الكمبودية



# គម្ពីរ
# អធិប្បាយ១ភាគ១០ចុង
# ក្រោយនៃអាល់គួរអាន

## អត្ថបទបន្ទាប់
## ច្បាប់សំខាន់ៗសម្រាប់អ្នកមូស្លីម

www.tafseer.info

# សេចក្ដីផ្ដើម

بِسْمِ اللهِ الرَّحْمَٰنِ الرَّحِيمِ

សេចក្ដីសរសើរទាំងឡាយសម្រាប់អល់ឡោះជាម្ចាស់។ សូមសិរីសួស្ដីកើតមានដល់ចៅហ្វាយរបស់យើង ណាពីរបស់យើង សំណព្វចិត្តរបស់យើង ជារ៉ស៊ូលុលឡោះរបស់
អល់ឡោះ។
បងប្អូនមូស្លីមប្រុសស្រីជាទីគោរព! ចូរជ្រាបចុះថា ចាំបាច់លើយើងទាំងអស់គ្នាត្រូវសិក្សាស្វែងយល់អំពីបួនប្រការ៖

ប្រការ១ ចំណេះវិជ្ជា៖ គឺការស្គាល់អល់ឡោះ ស្គាល់រ៉ស៊ូលុលឡោះ ស្គាល់សាសនាឥស្លាម។ ពីព្រោះគេមិនអនុញ្ញាតឱ្យគោរពសក្ការៈចំពោះអល់ឡោះដោយគ្មានចំណេះវិជ្ជានោះទេ។ បើសិនជានរណាម្នាក់ធ្វើដូច្នោះគឺវាសនារបស់គេនឹងត្រូវវង្វេងផ្លូវ។ ពិតណាស់ គេដូចជាពួកគ្រឹស្ទានដែរទាក់ទងនឹងរឿងនេះ។

ប្រការ២ ការអនុវត្ត៖ នរណាមានចំណេះវិជ្ជា ហើយមិនអនុវត្តតាមទេនោះ អ្នកនោះប្រៀបដូចជាពួកជីហ្វ(យ៉ាហ៊ូត)។ ពីព្រោះពួកគេដឹង តែពួកគេមិនអនុវត្តតាម។ អំពីល្បិចកលរបស់បិសាចស្ទៃហ្គនគឺពង្វក់មនុស្សឱ្យព្រាត់ចាកពីចំណេះវិជ្ជា។ វាល្បួងមនុស្សថា ខ្លួនគេត្រូវ
អល់ឡោះលើកលែងដោយសារភាពល្ងង់ខ្លៅរបស់ខ្លួន។ គេមិនដឹងថា អ្នកដែលមានលទ្ធភាពរៀន ហើយមិនរៀននោះគឺគ្មានលេសអ្វីដោះសារនោះទេ។ នេះគឺជាឧបាយកលរបស់សាសន៍ណាពីណួសខណៈដែលពួកគេ
﴿ جَعَلُوٓاْ أَصَٰبِعَهُمۡ فِيٓ ءَاذَانِهِمۡ وَٱسۡتَغۡشَوۡاْ ثِيَابَهُمۡ ﴾មានន័យថា៖ «ពួកគេយកម្រាមដៃរបស់ពួកគេញ៉ុកត្រចៀក ហើយយកប្រណាត់គ្របខ្លួនរបស់ពួកគេ»។ ដើម្បីកុំឱ្យមានលេសលើពួកគេ។

ប្រការ៣ ការអំពាវនាវ៖ ដោយសារពួកអ្នកប្រាជ្ញចេះដឹងនិងពួកអ្នកអំពាវនាវគឺជាអ្នកទទួលកេរដំណែលពីពួកណាពី។ ពិតណាស់ អល់ឡោះជាម្ចាស់បានដាក់ផ្ដាសាចំពោះអំបូរ អ៊ីស្រាអែលដោយសារពួកគេ
﴿ كَانُواْ لَا يَتَنَاهَوۡنَ عَن مُّنكَرٖ فَعَلُوهُۚ لَبِئۡسَ مَا كَانُواْ يَفۡعَلُونَ ﴾ មានន័យថា៖ «ពួកគេមិនហាមឃាត់គ្នាពីអំពើអាក្រក់ដែលពួកគេបានធ្វើ។ អាក្រក់ជាទីបំផុតនូវអ្វីដែលពួកគេបានប្រព្រឹត្ត»។
ការបង្រៀនគឺជាតព្វកិច្ចរួម បើសិនជាមាននរណាម្នាក់អនុវត្តគឺគ្រប់គ្រាន់ គ្មាននរណាម្នាក់មានបាបនោះទេ។ តែបើសិនជាទាំងអស់គ្នាបោះបង់មិនអនុវត្តគឺ

ទទួលបាបទាំងអស់គ្នា។
ប្រការ៤ ការអត់ធ្មត់ចំពោះបញ្ហាទាំងឡាយ៖ ក្នុងការបង្រៀនចំណេះវិជ្ជា ការអនុវត្តតាមចំណេះវិជ្ជា និងការអំពាវនាវមនុស្សទៅរកចំណេះវិជ្ជានេះ។
ដើម្បីចូលរួមចំណែក ក្នុងការលុបបំបាត់ភាពអវិជ្ជា និងការផ្តល់ភាពងាយស្រួលដល់ការស្វែងរកចំណេះវិជ្ជាដែលចាំបាច់។ក្នុងសៀវភៅដ៏សង្ខេបនេះ យើងបានប្រមូលចងក្រងនូវចំណេះវិជ្ជាទាក់ទងនឹងច្បាប់ឥស្លាមគ្រប់គ្រាន់ដើម្បីស្វែងយល់ព្រមជាមួយនឹងបីភាគចុងក្រោយនៃគម្ពីរអាល់គួរអាន និងការអធិប្បាយ។ ដោយសារបីភាគចុងក្រោយនេះមានការប្រាស្រ័យជាមួយនឹងការអានច្រើន ហើយសុភាសិតមួយបានពោលថា «មិនដឹងទាំងអស់ ក៏មិនគួរបោះបង់ចំណុចសំខាន់ៗនោះដែរ»។

យើងខ្ញុំយកចិត្តទុកដាក់ក្នុងការសរសេរសង្ខេបឱ្យខ្លី និងស្រង់យកតែហាទីសដែលត្រឹមត្រូវអំពីណាពីមូហាំម៉ាត់។ យើងខ្ញុំមិនមែនអះអាងថា យើងខ្ញុំចេះដល់កម្រិតកំពូលនោះទេ។ ពីព្រោះភាពពេញលេញនោះជាកម្មសិទ្ធិ សម្រាប់ព្រះអង្គផ្ទាល់។ នេះគ្រាន់តែជាការខិតខំប្រឹងប្រែងដ៏តិចតួចបំផុត។ បើសិនជាត្រឹមត្រូវគឺមកអំពីអល់ឡោះ។ តែបើសិនជាខុសឆ្គងគឺមកពីខ្លួនរបស់យើងខ្ញុំ និងបិសាចស្ស៊ៃតន។ អល់ឡោះជាម្ចាស់និងរ៉ស៊ូលុលឡោះរបស់ទ្រង់ស្អាតស្អំគ្មានកំហុសឆ្គងនោះទេ។ សូមអល់ឡោះមេត្តាអាណិតស្រលាញ់ចំពោះអ្នកដែលបានចង្អុលប្រាប់នូវកំហុសឆ្គងរបស់យើងខ្ញុំដោយការរិះគន់ដើម្បីស្ថាបនា។

សូមអល់ឡោះជាម្ចាស់ទ្រង់មេត្តាប្រទានពរជ័យដល់រាល់អ្នកដែលបានចូលរួមក្នុងការរៀបរៀង បោះពុម្ព ចែកចាយ អាន និងបង្រៀន។ សូមទ្រង់ទទួលយកនូវការប្រតិបត្តិរបស់ពួកគេ។ សូមទ្រង់បន្ថែមផលបុណ្យទ្វេដងជូនពួកគេ។

អល់ឡោះជាម្ចាស់ទ្រង់មហាដឹង សូមសិរីសួស្តីសន្តិភាពកើតមានដល់ថៅហ្វាយយើង ណាពីរបស់យើង មូហាំម៉ាត់ ក្រុមគ្រួសារគាត់ និងសហការីទាំងអស់របស់គាត់។

សៀវភៅនេះមានផ្តល់អនុសិទ្ធិដោយក្រុមអ្នកប្រាជ្ញចេះដឹង អ្នកសិក្សាស្រាវជ្រាវក្នុងពិភពឥស្លាម។ សម្រាប់ព័ត៌មានបន្ថែម ឬឧបត្ថម្ភ ឬចូលរួម ឬស្នើសុំសៀវភៅ សូមចូលទៅកាន់គេហទំព័រ /

Website: www.tafseer.info ប្រៃសនីយ៍ kmb@tafseer.info ។
បោះពុម្ពលើកទី១៦ មានបន្ថែម និងសម្រិតសម្រាំងអត្ថបទ ហ្សុលកៀកហ្ទះ ឆ្នាំ ១៤៤១ហ.ស

# តម្លៃនៃគម្ពីរអាល់គួរអាន៖

គម្ពីរអាល់គួរអានជាសម្តីរបស់អល់ឡោះមានតម្លៃជាងសម្តីផ្សេងៗទាំងអស់ ដូចជាអល់ឡោះទ្រង់មានតម្លៃលើសពីសត្វលោករបស់ទ្រង់ ហើយសូត្រគម្ពីរនេះប្រសើរលើសការសូត្រអ្វីទាំងអស់។

## តម្លៃនៃការរៀន បង្រៀន និងការសូត្រគម្ពីរអាល់គួរអាន៖

### ផលបុណ្យបង្រៀន

រ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា៖ (خيركم من تعلم القرآن وعلمه) មានន័យថា៖ «អ្នកដែលប្រសើរជាងគេក្នុងចំណោមពួកអ្នកគឺអ្នកដែលរៀននិងបង្រៀនអាល់គួរអាន»។

### ផលបុណ្យសូត្រ

គាត់បានមានប្រសាសន៍ថា៖(من قرأ حرفا من كتاب الله فله به حسنة والحسنة بعشر أمثالها) មានន័យថា៖ «**នរណាសូត្រមួយអក្សរនៃគម្ពីរអាល់គួរអាន នឹងទទួលបានផលបុណ្យមួយ ហើយផលបុណ្យមួយកើនទ្វេជាដប់**»។

អ៊ិបនូ រ៉ហ្ចាប់បាននិយាយថា៖ ការបន្ថែមផលបុណ្យទ្វេជាដប់ចាំបាច់សម្រាប់រាល់អំពើល្អទាំងឡាយ។ ពិតណាស់បន្ទូលរបស់អល់ឡោះបានបញ្ជាក់ថា៖ ﴿ مَن جَآءَ بِٱلۡحَسَنَةِ فَلَهُۥ عَشۡرُ أَمۡثَالِهَا ﴾ មានន័យថា៖ «**នរណាប្រតិបត្តិអំពើល្អមួយ នឹងទទួលបានទ្វេជាដប់**»។ ចំណែកឯការបន្ថែមទ្វេជាដប់គឺសម្រាប់អ្នកណាដែលអល់ឡោះទ្រង់សព្វព្រះទ័យបន្ថែម។ ជួនកាលការបន្ថែមខ្លះទ្វេជាចិតសិប និងច្រើនជាងនោះ។ មូលហេតុបន្ទាប់ពីពរជ័យរបស់អល់ឡោះ គឺដោយសារចិត្តស្ងប់ ការផ្ចង់ស្តាប់ និងការឈ្វេងយល់។ល។

## តម្លៃនៃការរៀន ទន្ទេញអាល់គួរអាន និងសូត្រស្ទាត់

រ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា៖

(مثل الذي يقرأ القرآن وهو حافظ له مع السفرة الكرام البررة ومثل الذي يقرأ وهو يتعاهده وهو عليه شديد فله أجران)

មានន័យថា៖ «ប្រៀបធៀបអ្នកដែលសូត្រអាល់គួរអាន ហើយទន្ទេញចាំ គឺនៅជាមួយនឹងពួកទេវតាដ៏ឧត្តមថ្លៃថ្លា ហើយប្រៀបធៀបអ្នកដែលសូត្រអាល់គួរអានខំប្រឹងសូត្រចុះឡើង ហើយមានការលំបាកដល់រូបគេគឺសម្រាប់រូបគេបានផលបុណ្យពីរ»។ គាត់បានមានប្រសាសន៍ទៀតថា៖

( يقال لصاحب القرآن اقرأ وارتق ورتل كما كنت ترتل في الدنيا فإن منزلتك عند آخر آية تقرأ بها )

មានន័យថា៖ «គេពោលទៅកាន់អ្នកសូត្រអាល់គួរអានថា ចូរសូត្រ ហើយឡើងឋានៈ ចូរសូត្រដូចដែលអ្នកធ្លាប់សូត្រនៅលោកីយ៍។ ពិតណាស់ឋានៈរបស់អ្នកផុតត្រឹមអាយ៉ាត់ចុងក្រោយដែលអ្នកបានសូត្រ»។





**អាល់ខត្តាពីយ៍បាននិយាយថា៖** ក្នុងហាទីសបានឱ្យដឹងថា ចំនួនអាយ៉ាត់អាល់គួរអានស្មើនឹងជាន់ឋានសួគ៌។ គេពោលទៅកាន់អ្នកសូត្រថា ចូរឡើងទៅកាន់ឋានសួគ៌តាមចំនួនអាយ៉ាត់ដែលអ្នកបានសូត្រ។ អ្នកសូត្រចាំគួរអានទាំងមូលគឺនឹងបានឡើងទៅកាន់ឋានសួគ៌ជាន់ខ្ពស់បំផុតនៅថ្ងៃបរលោក។ នរណាសូត្របានមួយផ្នែកនៃអាល់គួរអាន គឺនឹងទទួលបានឋានៈក្នុងឋានសួគ៌តាមនោះ។ ទីបញ្ចប់នៃផលបុណ្យចប់ត្រឹមការសូត្រចុងក្រោយបង្អស់។

## ផលបុណ្យអ្នកដែលមានកូនរៀនអាល់គួរអាន

រ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា៖

مَنْ قَرَأَ الْقُرْآنَ وَتَعَلَّمَهُ وَعَمِلَ بِهِ أُلْبِسَ يَوْمَ الْقِيَامَةِ تَاجًا مِنْ نُورٍ ضَوْءُهُ مِثْلُ ضَوْءِ الشَّمْسِ ، وَيُكْسَى وَالِدَيْهِ حُلَّتَانِ لَا يَقُومُ لَهُمَا الدُّنْيَا فَيَقُولَانِ : بِمَا كُسِينَا ؟ فَيُقَالُ : بِأَخْذِ وَلَدِكُمَا الْقُرْآنَ.

មានន័យថា៖ «នរណាសូត្រអាល់គួរអាន និងរៀន ហើយអនុវត្តតាមគឺគេពាក់មកុដពន្លឺឱ្យនៅថ្ងៃបរលោកដូចជាពន្លឺព្រះអាទិត្យ ហើយគេពាក់សម្លៀកបំពាក់សូត្រឱ្យឪពុកម្ដាយរបស់គេ។ អ្នកនៅឌុនយ៉ាមិនអាចឱ្យតម្លៃចំពោះពួកគាត់ទាំងពីរទេ។ ពួកគាត់និយាយថា ហេតុអ្វីបានគេពាក់អាវនេះឱ្យយើង? គេប្រាប់ថា ដោយកូនរបស់អ្នកទាំងពីរបានប្រកាន់តាមអាល់គួរអាន »។

## អាល់គួរអានសង្គ្រោះម្ចាស់របស់វានៅថ្ងៃបរលោក

រ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា (اقرءوا القرآن فإنه يأتي يوم القيامة شفيعاً لأصحابه) មានន័យថា «ចូរសូត្រអាល់គួរអាន ពិតណាស់ នៅថ្ងៃបរលោកវានឹងជួយសង្គ្រោះម្ចាស់របស់វា»។

(الصيام والقرآن يشفعان للعبد يوم القيامة ) មានន័យថា «បួសនិងអាល់គួរអានជួយសង្គ្រោះសម្រាប់មនុស្សលោកនៅថ្ងៃបរលោក»។

## ផលបុណ្យសូត្រ និងសិក្សាអាល់គួរអាន រួមគ្នា

(مَا اجْتَمَعَ قَوْمٌ فِي بَيْتٍ مِنْ بُيُوتِ اللَّهِ يَتْلُونَ كِتَابَ اللَّهِ وَيَتَدَارَسُونَهُ بَيْنَهُمْ إِلَّا نَزَلَتْ عَلَيْهِمْ السَّكِينَةُ وَغَشِيَتْهُمْ الرَّحْمَةُ وَحَفَّتْهُمْ الْمَلَائِكَةُ وَذَكَرَهُمْ اللَّهُ فِيمَنْ عِنْدَهُ)

មានន័យថា «គ្មានក្រុមណាមួយបានជួបជុំគ្នាក្នុងម៉ាស្ជិត សូត្រអាល់គួរអានសិក្សាស្វែងយល់រួមគ្នាពីគម្ពីរនេះ លើកលែងតែ ភាពនឹងនរបានចុះមកសណ្ឋិតលើពួកគេ ក្ដីមេត្តាគ្របដណ្ដប់ពួកគេ ហើយមានពួកទេវតាចុះមកចោមរោមពួកគេ ហើយអល់ឡោះរំឭកពួកគេប្រាប់អ្នកដែលនៅក្បែរទ្រង់»។

## ក្បួនច្បាប់នៃការសូត្រអាល់គួរអាន

### ស៊ីជីវធម៌សូត្រ

អិបនូ កាសៀរបានលើកឡើងពីរបៀបរបបសូត្រមានដូចជា មិនត្រូវកាន់ឬសូត្រលើកលែងតែខ្លួនរបស់គេស្អាតស្អំ(មានវូទូ)។ ត្រូវដុះធ្មេញមុនសូត្រ។ ត្រូវស្លៀកពាក់ឱ្យស្អាតបាត។ ត្រូវបែរទៅខាងកិបឡាត។ ត្រូវឈប់សូត្រនៅពេលស្ងាប។ ពុំ




ត្រូវកាត់ផ្តាច់ការសូត្រដោយសំដី លើកលែងតែចាំបាច់។ ត្រូវផ្តោតអារម្មណ៍ចំពោះការសូត្រ។ ដល់អាយ៉ាត់ស្តីអំពីការសន្យាត្រូវឈប់ ហើយបួងសួងសុំ ហើយដល់អាយ៉ាត់ស្តីអំពីការគំរាមកំហែងត្រូវទូអាសុំបញ្ចៀស។ មិនត្រូវបើកអាល់គួរអានចោល។ កុំយកអ្វីដាក់ពីលើអាល់គួរអាន។ ពុំត្រូវសូត្រឮសំឡេងខ្លាំងៗប្រណាំងគ្នា។ ពុំត្រូវសូត្រនៅផ្សារ និងកន្លែងអ៊ូអរ។

## របៀបសូត្រ

• សូត្រអាល់គួរអាន និងហ្ស៊ីកៀរក្នុងសឡាត និងក្រៅសឡាត មិនចាត់ទុកជាការសូត្រ លុះត្រាតែស្តាប់ឮខ្លួនឯង ដោយពុំខានដល់អ្នកដទៃ។

• ត្រូវសូត្រយឺតៗ គេសួរអ៊ើណើស អំពីការសូត្ររបស់ណាពី គាត់បាននិយាយថា «គាត់បន្លឺសំលេងបង្អូសវែង នៅពេលគាត់សូត្រ( بسم الله الرحمن الرحيم ) គាត់បង្អូសសំឡេង( بسم الله ) និង( الرحمن ) និង ( الرحيم )»។

## បរិមាណនៃការសូត្រ

សហាហ្ពាត់របស់ណាពីបានកំណត់សម្រាប់ខ្លួនឯងនូវពេលវេលាមួយចំណែកសម្រាប់អាល់គួរអាន។ ពួកគាត់មិនបញ្ចប់ជាប្រចាំរយៈពេលតិចជាងប្រាំពីរថ្ងៃ។ ពិតណាស់ មានរីវ៉ាយ៉ាត់ហាមបញ្ចប់ការសូត្រអាល់គួរអានតិចជាងបីថ្ងៃ។

## សូត្រតាមការ ទន្ទេញចាំ

បើសិនជាអ្នកសូត្រនោះតាមរយៈការទន្ទេញចាំ គេអាចត្រិះរិះពិចារណា ផ្តោតអារម្មណ៍ និងស្វែងយល់អត្ថន័យខ្លឹមសារបានប្រសើរជាងអ្នកសូត្រមើលអាល់គួរអាន។ បើសិនជា សូត្រមើលក៏បាន សូត្រមាត់ទទេក៏បានគឺសូត្រមើលប្រសើរជាង។

## បណ្តាំ

ចូរយកចិត្តទុកដាក់ចំពោះការចំណាយពេលដើម្បីសូត្រអាល់គួរអាន។ សូមកំណត់ពេលសម្រាប់ខ្លួនឯង សូមកុំរំលងចោលដោយពុំបានសូត្រ ទោះរវល់យ៉ាងណាក៏ដោយ។ តិចតួចតែជាប់លាប់ប្រសើរជាងច្រើនតែមិនជាប់លាប់។ បើសិនជាភ្លេច ឬដេកលក់ ចូរសូត្រសងវិញនៅថ្ងៃស្អែក។

(مَنْ نَامَ عَنْ حِزْبِهِ أَوْ عَنْ شَيْءٍ مِنْهُ فَقَرَأَهُ فِيمَا بَيْنَ صَلَاةِ الْفَجْرِ وَصَلَاةِ الظُّهْرِ كُتِبَ لَهُ كَأَنَّمَا قَرَأَهُ مِنَ اللَّيْلِ)

មានន័យថា «**នរណាដេកភ្លេចសូត្រមួយផ្នែកនៃអាល់គួរអាន ឬភ្លេចអ្វីមួយក្នុងអាល់គួរអានមិនបានសូត្រ បន្ទាប់មកគេសូត្រនៅចន្លោះពេលសឡាតស៊ូហ្ពោះ និងសឡាតហ្ស៊ូហ្ស គឺគេកត់ត្រាផលបុណ្យឱ្យដូចគេសូត្រនៅពេលយប់ដែរ**»។

ចូរកុំឱ្យខ្លួនឯងក្លាយជាមនុស្សដែលបោះបង់ និងភ្លេចអាល់គួរអាន ទោះជាប្រភេទណាក៏ដោយ។ដូចជាបោះបង់ការសូត្រ ឬការអាន ឬបោះបង់ការស្វែងយល់អត្ថន័យ ឬបោះបង់ការអនុវត្ត ឬបោះបង់សូត្រព្យាបាលជំងឺ។





# ស៊ូរ៉ោះ អាល់ហ្វាទីហះ

**គោលបំណងនៃស៊ូរ៉ោះ**

បញ្ជាក់ពីភាពជាខ្ញុំអល់ឡោះ និងការគោរពដ៏ពិតប្រាកដទៅចំពោះទ្រង់តែមួយគត់។

**តាហ្ស៊ៀរ**

**គេហៅស៊ូរ៉ោះនេះថាហ្វាទីហះ(الفاتحة)ដោយសារគេចាប់ផ្ដើមអាល់គួរអាននឹងស៊ូរ៉ោះនេះ។ គេឱ្យឈ្មោះថាអុំមុលគួរអាន (أم القرآن) ដោយមានប្រមូលផ្ដុំនូវប្រធានបទក្នុងវា ដូចជា ជំនឿចំពោះអល់ឡោះ ការគោរពសក្ការៈ បង្ហាញពីប្រវត្តិនឹងអ្វីផ្សេងៗទៀត។ ហើយវាជាស៊ូរ៉ោះដែលខ្ពង់ខ្ពស់បំផុតនៅក្នុងគួរអាន ហើយវាគឺ សាប់អុំលម៉ាសានីយ៍ (السبع المثاني)។**

بِسۡمِ ٱللَّهِ ٱلرَّحۡمَٰنِ ٱلرَّحِيمِ ﴿١﴾ ٱلۡحَمۡدُ لِلَّهِ رَبِّ ٱلۡعَٰلَمِينَ ﴿٢﴾ ٱلرَّحۡمَٰنِ ٱلرَّحِيمِ ﴿٣﴾
مَٰلِكِ يَوۡمِ ٱلدِّينِ ﴿٤﴾ إِيَّاكَ نَعۡبُدُ وَإِيَّاكَ نَسۡتَعِينُ ﴿٥﴾ ٱهۡدِنَا ٱلصِّرَٰطَ
ٱلۡمُسۡتَقِيمَ ﴿٦﴾ صِرَٰطَ ٱلَّذِينَ أَنۡعَمۡتَ عَلَيۡهِمۡ غَيۡرِ ٱلۡمَغۡضُوبِ عَلَيۡهِمۡ وَلَا ٱلضَّآلِّينَ ﴿٧﴾

(1) យើងចាប់ផ្ដើមនឹងការសុំជំនួយពីអល់ឡោះលើការសូត្រដោយក្ដីមេត្តាដែលរីកស្គុះសាយដល់ម៉ោខ្លូកទាំងអស់និងក្ដីមេត្តាជាពិសេសសម្រាប់អ្នកមានជំនឿក្នុងចំណោមពួកគេ។

(2) ការសរសើរយ៉ាងពេញលេញទៅចំពោះអល់ឡោះទាំងហ្សាត(អត្តៈ) លក្ខណៈនិង ទង្វើរបស់ទ្រង់។ព្រោះទ្រង់ជាអ្នកបង្កើតអ្វីៗទាំងអស់ ហើយជាស្ដេច និង ជាអ្នកគ្រប់គ្រង កិច្ចការរបស់ពួកគេ ហើយនិងជាអ្នកចិញ្ចឹម ពួកគេដោយនៀកម៉ាត់ទូទៅនិងជាពិសេស។

(3) الرحمن គឺជាក្ដីមេត្តាដែលរីកសុះសាយដល់ម៉ោខ្លូកទាំងអស់ ហើយ الرحيم គឺជាក្ដីមេត្តាជាពិសេសសម្រាប់អ្នកមានជំនឿក្នុងចំណោមពួកគេ។

(4) ទ្រង់ជាស្ដេចក្នុងថ្ងៃជំនុំជំរះ វាគឺជាថ្ងៃគីយ៉ាម៉ះ ដោយការតបស្នងដល់ខ្ញុំរបស់ទ្រង់តាមទង្វើរបស់ពួកគេ។ហើយពួកគេនឹងទទួលបានទៅតាមអ្វីដែលបានសា។ហើយក្នុងថ្ងៃនោះអល់ឡោះបានសួរថា (لِمَنِ الْمُلْكُ الْيَوْمَ) (តើការគ្រប់គ្រងនៅថ្ងៃនេះជាកម្មសិទ្ធិរបស់អ្នក ណា?) គ្មាននរណាម្នាក់ឆ្លើយតបឡើយ សម្បីគេឋានៈខ្ពស់យ៉ាងណាក៏ដោយ ហើយក្នុង ពេលនោះអល់ឡោះបានឆ្លើយតបដោយអង្គឯងថា(لِلَّهِ الْوَاحِدِ الْقَهَّارِ) غافر ١٦ (គឺជាកម្មសិទ្ធិរបស់អល់ឡោះ ជាម្ចាស់តែមួយគត់ ដែលមហាខ្លាំងក្លា)។

(5) ពួកយើងខ្ញុំថ្វាយការគោរពសក្ការៈនិងការគោរពតាមជាពិសេសចំពោះទ្រង់តែមួយគត់ហើយពួកយើងខ្ញុំមិនគោរពសក្ការៈនរណាផ្សេងក្រៅពីទ្រង់ឡើយ។ហើយចំពោះទ្រង់តែមួយគត់ដែលពួកយើងខ្ញុំសុំជំនួយរាល់កិច្ចការរបស់យើង។អំពើល្អទាំងឡាយស្ថិតនៅក្នុងកណ្ដាប់ដៃរបស់ទ្រង់
ពួកយើងខ្ញុំមិនគោរពសក្ការៈនិងសុំជំនួយពីនរណាផ្សេងក្រៅពីទ្រង់ឡើយ។

(6) សូមទ្រង់ចង្អុលបង្ហាញដល់យើងខ្ញុំផងចុះទៅរកមាគ៌ាដ៏ត្រឹមត្រូវ។ជាផ្លូវរបស់ឥស្លាមដែលមិនវៀចវេរឡើយហើយសូមឱ្យយើងខ្ញុំស្ថិតស្ថេរលើវាផងចុះ។

(7) គឺមាគ៌ារបស់បណ្ដាអ្នកដែលទ្រង់បានប្រទាននៀកម៉ាត់ដល់ពួកគេដូចជាបណ្ដាណាពីបណ្ដាអ្នកដែលជឿតាមណាពីដ៏ពិតប្រាកដបណ្ដាអ្នកដែលពលីកម្មក្នុងមាគ៌ារបស់អល់ឡោះនឹងបណ្ដាអ្នកដែលសាងអំពើល្អ។ហើយអ្នកទាំងនោះគឺជាមិត្តភក្ដិដ៏ល្អបំផុត។ពុំមែនជា(មាគ៌ា)អ្នកដែលត្រូវគេខឹងសម្បាចំពោះពួកគេដោយពួកគេបានដឹងពីការពិតតែពួកគេ



មិនអនុវត្តតាមឡើយដូចជាពួកយ៉ូដានិងពុំមែនជា(មាគ៌ា)ពួកដែលវង្វេងអំពីការពិតដែល
ពួកគេមិនទទួលបានការចង្អុលបង្ហាញទៅរកវាដោយពួកគេគេចវេសពីការទាមទារការ
ពិតនិងការចង្អុលបង្ហាញទៅរកវាដូចជាពួកណាសរ៉(គ្រឹស្ទាន)។

## ស៊ូរ៉ោះអាល់មូជើទើឡះ

**គោលបំណងនៃស៊ូរ៉ោះ**

បង្ហាញពីភាពមហាដឹងរបស់អល់ឡោះដែលគ្របដណ្តប់គ្រប់ទីកន្លែង។អប់រំពីការ
ឃើញគ្រប់ពេលរបស់ទ្រង់។និងការព្រមានពីការរំលោភបំពាន។

**តាហ្សៀរ**

قَدۡ سَمِعَ ٱللَّهُ قَوۡلَ ٱلَّتِي تُجَٰدِلُكَ فِي زَوۡجِهَا وَتَشۡتَكِيٓ إِلَى ٱللَّهِ وَٱللَّهُ يَسۡمَعُ تَحَاوُرَكُمَآۚ إِنَّ ٱللَّهَ سَمِيعُۢ بَصِيرٌ

1 ពិតណាស់អល់ឡោះទ្រង់ស្តាប់លឺសំដីរបស់ស្រ្តី( នាងគឺខៅឡះ ពិនតី សាក់ឡើពះ )
ដែលនាង បានជជែកដេញដោលជាមួយអ្នក( មូហាំម៉ាត់ )ក្នុងរឿងស្វាមីរបស់នាង( គាត់
គឺអោស ពិន សមិុត )។ហើយបានត្អូញត្អែរទៅចំពោះអល់ឡោះនូវអ្វីដែលប្តីរបស់នាង
បានធ្វើ។ហើយពិតណាស់អល់ឡោះឮនូវការជជែកគ្នារវាងអ្នកទាំងពីរ។ គ្មានអ្វីមួយអាច
លាក់បាំងពីទ្រង់បានឡើយពិតប្រាកដណាស់អល់ឡោះឮរាល់សម្តីរបស់ខ្ញុំបំរើទ្រង់
ហើយឃើញរាល់កាយវិការរបស់ពួកគេគ្មានអ្វីមួយអាចលាក់បាំងពីទ្រង់បានឡើយ។

ٱلَّذِينَ يُظَٰهِرُونَ مِنكُم مِّن نِّسَآئِهِم مَّا هُنَّ أُمَّهَٰتِهِمۡۖ إِنۡ أُمَّهَٰتُهُمۡ إِلَّا ٱلَّٰٓـِٔي وَلَدۡنَهُمۡۚ
وَإِنَّهُمۡ لَيَقُولُونَ مُنكَرٗا مِّنَ ٱلۡقَوۡلِ وَزُورٗاۚ وَإِنَّ ٱللَّهَ لَعَفُوٌّ غَفُورٞ ٢
وَٱلَّذِينَ يُظَٰهِرُونَ مِن نِّسَآئِهِمۡ ثُمَّ يَعُودُونَ لِمَا قَالُواْ فَتَحۡرِيرُ رَقَبَةٖ مِّن قَبۡلِ أَن يَتَمَآسَّاۚ
ذَٰلِكُمۡ تُوعَظُونَ بِهِۦۚ وَٱللَّهُ بِمَا تَعۡمَلُونَ خَبِيرٞ ٣ فَمَن لَّمۡ يَجِدۡ فَصِيَامُ شَهۡرَيۡنِ
مُتَتَابِعَيۡنِ مِن قَبۡلِ أَن يَتَمَآسَّاۖ فَمَن لَّمۡ يَسۡتَطِعۡ فَإِطۡعَامُ سِتِّينَ مِسۡكِينٗاۚ ذَٰلِكَ لِتُؤۡمِنُواْ
بِٱللَّهِ وَرَسُولِهِۦۚ وَتِلۡكَ حُدُودُ ٱللَّهِۗ وَلِلۡكَٰفِرِينَ عَذَابٌ أَلِيمٌ ٤

2 ពួកដែលនិយាយពាក្យហ្ស៊ីហើរចំពោះភរិយារបស់ពួកគេដោយពួកគេនិយាយទៅ
កាន់ភរិយារបស់ពួកគេថា៖នាងឯងចំពោះខ្ញុំដូចជាខ្នងម្តាយរបស់ខ្ញុំ។ នេះគ្រាន់តែជា
ពាក្យកុហកចេញពីមាត់របស់ពួកគេតែប៉ុណ្ណោះ។ពួកនាងមិនមែនជាម្តាយរបស់ពួក
គេទេ។តាមពិតម្តាយរបស់ពួកគេគឺជាអ្នកដែលបានបង្កើតពួកគេ។ប្រាកដណាស់ពួក
គេបាននិយាយនូវពាក្យសំដីដ៏អាក្រក់និងភូតកុហក។ហើយពិតប្រាកដណាស់អល់
ឡោះមហាអធ្យាស្រ័យមហាអភ័យទោស។ដោយទ្រង់ចាត់ទុកការបង់ផាកពិន័យលើ
ពួកគេជាការលោះខ្លួនពីអំពើអាក្រក់នេះ។

3 ពួកអ្នកដែលពោលពាក្យសំដីដ៏អាក្រក់ចំពោះប្រពន្ធរបស់ខ្លួនបន្ទាប់មកពួកគេ
ចង់ត្រឡប់មករួមដំណេកជាមួយនាងវិញនូវអ្វីដែលពួកគេបាននិយាយចំពោះពួក
នាងគឺពួកគេ( ស្វាមី )ត្រូវពិន័យដោយដោះលែងខ្ញុំបម្រើម្នាក់មុនពេលពួកគេរួម
ដំណេកជាមួយនាងវិញ។នោះគឺជាច្បាប់ដែលគេបង្គាប់ពួកអ្នកឱ្យអនុវត្តតាមដើម្បី
ជៀសវាងអំពីការប្រព្រឹត្តអំពើហ្ស៊ីហើរនេះ។ហើយអល់ឡោះដឹងជ្រៅជ្រះបំផុតនូវអ្វីដែល
ពួកអ្នកប្រព្រឹត្ត។គ្មានសកម្មភាពអ្វីអាចលាក់បាំងពីទ្រង់បានឡើយ។

4 ចំពោះអ្នកដែលគ្មានខ្ញុំបម្រើដើម្បីដោះលែងដូច្នេះគេត្រូវបួសពីរខែបន្តបន្ទាប់គ្នា
មិនត្រូវដាច់បួសនៅថ្ងៃណាមួយក្នុងកំឡុងពីរខែនេះឡើយ។មុនពេលពួកគេរួម
ដំណេកជាមួយភរិយាដែលគេបានហ្ស៊ីហើរលើនាង។ចំពោះអ្នកដែលគ្មានសមត្ថភាព




បុសពីរខែបន្តបន្ទាប់គ្នា។ដូច្នេះគេត្រូវផ្តល់ចំណីអាហារដល់អ្នកក្រចំនួន៦០នាក់។ នោះគឺជាច្បាប់ដែលយើងបានកាត់ក្តីនឹងវាដើម្បីឱ្យពួកអ្នកជឿថាវាជាបទបញ្ញាពីអល់ឡោះហើយពួកអ្នកត្រូវអនុវត្តតាមវា។នោះហើយគឺជាការកំណត់របស់អល់ឡោះដែលទ្រង់បានកំណត់មកលើខ្ញុំរបស់ទ្រង់ហើយពួកអ្នកមិនត្រូវបំពានឡើយ។ហើយសម្រាប់អ្នកដែលបំពានល្មើសនឹងច្បាប់របស់អល់ឡោះគឺនឹងទទួលទារុណកម្មដ៏ឈឺចាប់។

إِنَّ ٱلَّذِينَ يُحَآدُّونَ ٱللَّهَ وَرَسُولَهُۥ كُبِتُوا۟ كَمَا كُبِتَ ٱلَّذِينَ مِن قَبْلِهِمْ ۚ وَقَدْ أَنزَلْنَآ
ءَايَٰتٍۭ بَيِّنَٰتٍ ۚ وَلِلْكَٰفِرِينَ عَذَابٌ مُّهِينٌ ﴿٥﴾ يَوْمَ يَبْعَثُهُمُ ٱللَّهُ جَمِيعًا فَيُنَبِّئُهُم بِمَا
عَمِلُوٓا۟ ۚ أَحْصَىٰهُ ٱللَّهُ وَنَسُوهُ ۚ وَٱللَّهُ عَلَىٰ كُلِّ شَىْءٍ شَهِيدٌ ﴿٦﴾ أَلَمْ تَرَ أَنَّ ٱللَّهَ يَعْلَمُ مَا فِى
ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ ۖ مَا يَكُونُ مِن نَّجْوَىٰ ثَلَٰثَةٍ إِلَّا هُوَ رَابِعُهُمْ وَلَا خَمْسَةٍ إِلَّا هُوَ
سَادِسُهُمْ وَلَآ أَدْنَىٰ مِن ذَٰلِكَ وَلَآ أَكْثَرَ إِلَّا هُوَ مَعَهُمْ أَيْنَ مَا كَانُوا۟ ۖ ثُمَّ يُنَبِّئُهُم بِمَا
عَمِلُوا۟ يَوْمَ ٱلْقِيَٰمَةِ ۚ إِنَّ ٱللَّهَ بِكُلِّ شَىْءٍ عَلِيمٌ ﴿٧﴾

(5) ពិតប្រាកដពួកអ្នកដែលប្រឆាំងនឹងអល់ឡោះនិងរ៉សូលុលឡោះរបស់ទ្រង់ពួកគេនឹងត្រូវអាប់ឱននឹងអាម៉ាស់ដូចជាពួកអ្នកជំនាន់មុនពួកគេដែរ។ហើយជាការពិតណាស់យើងបានបញ្ចុះនូវភស្តុតាងៗយ៉ាងច្បាស់លាស់។ហើយសម្រាប់ពួកអ្នកដែលប្រឆាំងនឹងអល់ឡោះ រ៉សូលុលឡោះ និងអាយ៉ាត់ របស់ទ្រង់ពួកគេនឹងត្រូវទារុណកម្មយ៉ាងអាម៉ាស់។

(6) នៅថ្ងៃដែលអល់ឡោះបង្កើតឱ្យរស់ឡើងវិញក្នុងសភាពតែមួយ។គ្មាននរណាម្នាក់ក្នុងចំណោមពួកគេនៅសេសសល់មិនបានរស់ឡើងវិញ។ទ្រង់នឹងប្រាប់ពួកគេពីទង្វើដែលពួកគេបានធ្វើកាលនៅលោកិយនៃអំពើអាក្រក់។អល់ឡោះបានគណនាទុកទាំងអស់គ្មានអ្វីលាក់បាំងពីទ្រង់ឡើយ។ពួកគេភ្លេចមិនបានចាំវា។ហើយពួកគេនឹងឃើញវានៅក្នុងបញ្ជីកំណត់ត្រារបស់ពួកគេដោយគ្មានខ្វះខាតបន្តិចណាឡើយ។អល់ឡោះទ្រង់ទតឃើញ និងមើលឃើញអ្វីគ្រប់យ៉ាងគ្មានអ្វីអាចលាក់កំបាំងពីទ្រង់បានឡើយ។

(7) តើអ្នកមិនបានឃើញទេឬពិតប្រាកដណាស់ អល់ឡោះដឹងនូវអ្វីៗដែលមាននៅលើមេឃជាច្រើនជាន់និងអ្វីៗដែលមាននៅលើផែនដីនោះ?ដោយគ្មានអ្វីដែលនៅចន្លោះវាទាំងពីរអាចលាក់បាំងនឹងទ្រង់បានឡើយៗគ្មានការជជែកគ្នាស្ងាត់ៗរវាងបុរសបីនាក់លើកលែងតែទ្រង់ជាអ្នកទីបួនក្នុងការដឹងឮរបស់ទ្រង់។គ្មានការជជែកគ្នាស្ងាត់ៗរវាងគ្នាប្រាំនាក់ទេលើកលែងតែទ្រង់ជាអ្នកទីប្រាំមួយក្នុងការដឹងឮរបស់ទ្រង់។ទោះជាចំនួនតិចជាងនេះឬច្រើនជាងនេះក៏ដោយគឺការដឹងឮរបស់ទ្រង់នៅជាមួយពួកគេជានិច្ចទោះជានៅទីណាក៏ដោយ។គ្មានការជជែកណាអាចលាក់បាំងនឹងទ្រង់បានឡើយ។បន្ទាប់មកនៅថ្ងៃបរលោកទ្រង់នឹងប្រាប់ពួកគេឱ្យដឹងនូវអ្វីដែលពួកគេបានប្រព្រឹត្ត។ពិតប្រាកដណាស់អល់ឡោះមហាដឹងនូវអ្វីៗទាំងអស់នូវរឿងសម្ងាត់និងបើកចំហ។គ្មានអាចកំបាំងអ្វីលាក់បាំងនឹងទ្រង់ឡើយ។

أَلَمْ تَرَ إِلَى ٱلَّذِينَ نُهُوا۟ عَنِ ٱلنَّجْوَىٰ ثُمَّ يَعُودُونَ لِمَا نُهُوا۟ عَنْهُ وَيَتَنَٰجَوْنَ بِٱلْإِثْمِ وَٱلْعُدْوَٰنِ
وَمَعْصِيَتِ ٱلرَّسُولِ وَإِذَا جَآءُوكَ حَيَّوْكَ بِمَا لَمْ يُحَيِّكَ بِهِ ٱللَّهُ وَيَقُولُونَ فِىٓ أَنفُسِهِمْ لَوْلَا
يُعَذِّبُنَا ٱللَّهُ بِمَا نَقُولُ ۚ حَسْبُهُمْ جَهَنَّمُ يَصْلَوْنَهَا ۖ فَبِئْسَ ٱلْمَصِيرُ ﴿٨﴾ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓا۟
إِذَا تَنَٰجَيْتُمْ فَلَا تَتَنَٰجَوْا۟ بِٱلْإِثْمِ وَٱلْعُدْوَٰنِ وَمَعْصِيَتِ ٱلرَّسُولِ وَتَنَٰجَوْا۟ بِٱلْبِرِّ وَٱلتَّقْوَىٰ



وَٱتَّقُواْ ٱللَّهَ ٱلَّذِىٓ إِلَيۡهِ تُحۡشَرُونَ ﴿٩﴾ إِنَّمَا ٱلنَّجۡوَىٰ مِنَ ٱلشَّيۡطَٰنِ لِيَحۡزُنَ ٱلَّذِينَ ءَامَنُواْ
وَلَيۡسَ بِضَآرِّهِمۡ شَيۡـًٔا إِلَّا بِإِذۡنِ ٱللَّهِۚ وَعَلَى ٱللَّهِ فَلۡيَتَوَكَّلِ ٱلۡمُؤۡمِنُونَ ﴿١٠﴾

(8) តើអ្នកមិនបានឃើញទេឬ?ពួកយ៉ាហ៊ូតកាលណាមានបុរសមានជំនឿម្នាក់ដើរ
កាត់ពួកគេពួកគេនាំគ្នាជជែកគ្នាស្ងាត់ៗដើម្បីអ្នកមានជំនឿនោះសុង្ស័យអាក្រក់។
ហេតុនេះទើបអល់ឡោះបានហាមឃាត់ពួកគេពីការជជែកគ្នាស្ងាត់ៗ។បន្ទាប់មកពួក
គេត្រឡប់ទៅប្រព្រឹត្តនូវអ្វីដែលអល់ឡោះបានហាមឃាត់។ពួកគេនៅតែជជែកគ្នាស្ងា
ត់ៗនូវអ្វីដែលជាអំពើបាបដូចជាការនិយាយដើមពួកអ្នកមានជំនឿនិងជាប្រការដែល
នាំឱ្យក្លាយជាសត្រូវនឹងគ្នានិងជាការប្រឆាំងនិងល្មើសចំពោះរ៉ស៊ូលុលឡោះ។នៅ
ពេលពួកគេមកជួបអ្នកពួកគេស្វាគមន៍អ្នកនូវអ្វីដែលអល់ឡោះទ្រង់មិនបានស្វាគមន៍
ចំពោះអ្នក។ដោយពួកគេពោលថា (السام عليكم) ។មានន័យថាដាក់បណ្តាសាឱ្យស្លា
ប់។ពួកគេនិយាយថាបើមុហាំម៉ាត់ជាណាពីមែននោះអល់ឡោះច្បាស់ជានឹងដាក់
ទណ្ឌកម្មលើពួកយើងដោយសារពាក្យសម្តីប្រមាថមើលងាយរបស់ពួកយើងចំពោះ
គេ។ពិតណាស់ទារុណកម្មភ្លើងនរកចាហាន់ណាំគ្រប់គ្រាន់សម្រាប់ពួកគេ។ពួកគេនឹង
ចូលក្នុងភ្លើងនរកនេះ។ជាកន្លែងត្រលប់ដ៏អាក្រក់បំផុតរបស់ពួកគេ។
(9) ឱបណ្តាអ្នកដែលមានជំនឿចំពោះអល់ឡោះចូរពួកអ្នកអនុវត្តតាមអ្វីដែលច្បាប់
បានកំណត់មកលើពួកអ្នក។ចូរពួកអ្នកកុំជជែកគ្នាស្ងាត់ៗពីរឿងបាបកម្មឬជាប្រការ
ដែលនាំឱ្យក្លាយជាសត្រូវនឹងគ្នាឬជាការល្មើសបំពាននិងប្រឆាំងនឹងរ៉ស៊ូលុលឡោះ។កុំ
ឱ្យពួកអ្នកដូចជាពួកយ៉ាហ៊ូត។តែចូរជជែកគ្នាពីប្រការល្អនឹងភាពកោតខ្លាចចំពោះអល់
ឡោះនឹងបោះបង់បទល្មើស។ចូរកោតខ្លាចចុះចំពោះអល់ឡោះដោយអនុវត្តតាមបទ
បញ្ជារបស់ទ្រង់និងជៀសវាងការហាមឃាត់របស់ទ្រង់ហើយគេនឹងប្រមូលពួកអ្នកទៅ
ឱ្យទ្រង់ជំនុំជម្រះក្នុងថ្ងៃគីយ៉ាម៉ាត់ និងតបស្នងឱ្យពួកអ្នកតាមទង្វើរបស់ពួកអ្នក។
(10) តាមពិតការជជែកគ្នាស្ងាត់ៗដោយបាបកម្មការបំពារបំពាន និងការប្រឆាំងនឹងរ៉ស៊ូ
លុលឡោះ គឺមកពីស្ហៃតន់ជាការល្បួងនិងការបោកបញ្ឆោតរបស់វា។ដែលធ្វើឱ្យពួកអ្នក
មានជំនឿកើតទុក្ខដោយឧបាយកលរបស់ស្ហៃតន។ស្ហៃតនឬការបោកបញ្ឆោតនោះ
មិននាំឱ្យមានគ្រោះថ្នាក់ដល់ពួកអ្នកមានជំនឿជាដាច់ខាត។លើកលែងតែមានការ
អនុញ្ញាតអំពីអល់ឡោះនិងដោយការសព្វព្រះទ័យរបស់ទ្រង់។ហើយចំពោះអល់ឡោះ
តែមួយគត់ដែល បណ្តាអ្នកមានជំនឿប្រគល់ការទុកចិត្តរាល់កិច្ចការរបស់ពួកគេ។

**បន្ទាប់ពីអល់ឡោះបានរំលឹកពីសុជីវធម៌ក្នុងពាក្យសំដីហើយ អល់ឡោះក៏បានរំលឹកពី
សុជីវធម៌ក្នុង កម្មវិធីជួបជុំដោយទ្រង់បានមានបន្ទូលថា៖**

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا قِيلَ لَكُمۡ تَفَسَّحُواْ فِي ٱلۡمَجَٰلِسِ فَٱفۡسَحُواْ يَفۡسَحِ ٱللَّهُ لَكُمۡۖ وَإِذَا
قِيلَ ٱنشُزُواْ فَٱنشُزُواْ يَرۡفَعِ ٱللَّهُ ٱلَّذِينَ ءَامَنُواْ مِنكُمۡ وَٱلَّذِينَ أُوتُواْ ٱلۡعِلۡمَ دَرَجَٰتٖۚ وَٱللَّهُ
بِمَا تَعۡمَلُونَ خَبِيرٞ ﴿١١﴾

(11) ឱបណ្តាអ្នកដែលមានជំនឿចំពោះអល់ឡោះចូរពួកអ្នកអនុវត្តតាមអ្វីដែលច្បាប់
បានកំណត់មកលើពួកអ្នក។កាលណាគេនិយាយទៅកាន់ពួកអ្នកថាចូរសម្រួលកន្លែង
អង្គុយឱ្យទូលាយចូរពួកអ្នកសម្រួលកន្លែងអង្គុយឱ្យទូលាយនោះអល់ឡោះនឹងធ្វើឱ្យ
ពួកអ្នកទូលាយវិញនៅក្នុងជីវិតរស់នៅលើលោកិយនឹងក្នុងឋានសួគ៌។បើសិនជាគេសុំ
ឱ្យពួកអ្នកអង្គុយខ្លះក្រោកចេញដើម្បីទុកកន្លែងឱ្យពួកអ្នកប្រាជ្ញបេះដឹងខាងស្ហានា
អង្គុយគឺពួកគេគប្បីក្រោកចេញ។អល់ឡោះទ្រង់លើកតម្កើងពួកអ្នកមានជំនឿក្នុង





ចំណោមពួកអ្នកនិងពួកអ្នកដែលមានចំណេះដឹងឱ្យមានឋានៈខ្ពង់ខ្ពស់។ហើយអល់ឡោះដឹង ជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។គ្មានទង្វើអ្វីអាចលាក់បាំងនឹងអល់ឡោះបានទេ។ហើយពួកអ្នកនឹងទទួលបានការតបស្នងទៅតាមអ្វីដែលអ្នកបានប្រព្រឹត្ត។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا نَٰجَيْتُمُ ٱلرَّسُولَ فَقَدِّمُواْ بَيْنَ يَدَيْ نَجْوَىٰكُمْ صَدَقَةً ذَٰلِكَ خَيْرٌ لَّكُمْ
وَأَطْهَرُ فَإِن لَّمْ تَجِدُواْ فَإِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ ﴿١٢﴾
ءَأَشْفَقْتُمْ أَن تُقَدِّمُواْ بَيْنَ يَدَيْ نَجْوَىٰكُمْ صَدَقَٰتٍ فَإِذْ لَمْ تَفْعَلُواْ وَتَابَ ٱللَّهُ عَلَيْكُمْ فَأَقِيمُواْ
ٱلصَّلَوٰةَ وَءَاتُواْ ٱلزَّكَوٰةَ وَأَطِيعُواْ ٱللَّهَ وَرَسُولَهُۥ وَٱللَّهُ خَبِيرٌۢ بِمَا تَعْمَلُونَ ﴿١٣﴾

12 នៅពេលដែលសហាហ្ពះបានមកពិភាក្សារឿងសម្ងាត់ជាច្រើនជាមួយរ៉ស៊ូលុលឡោះអល់ឡោះបានមានបន្ទូលថា៖នៅពេលណាពួកអ្នកចង់ពិភាក្សារឿងសម្ងាត់អ្វីមួយជាមួយនឹងរ៉ស៊ូលុលឡោះ ចូរពួកអ្នកបរិច្ចាគជាមុនសិនមុននឹងពួកអ្នកពិភាក្សារឿងសម្ងាត់នោះ។ការបរិច្ចាគដូច្នេះ គឺជាការប្រសើរនិងស្អាតស្អំបំផុតសម្រាប់ពួកអ្នក។ព្រោះការគោរពប្រតិបត្តិចំពោះអល់ឡោះវាលាងជម្រះចិត្តទាំងឡាយ។ហើយប្រសិនបើពួកអ្នកគ្មានលទ្ធភាពបរិច្ចាគទេនោះ។ពួកអ្នកអាចនិយាយរឿងសម្ងាត់បានដោយពុំចាំបាច់បរិច្ចាគ។ពិតប្រាកដណាស់អល់ឡោះមហាអភ័យទោសរាល់កំហុសឆ្គងហើយមហាអាណិតស្រឡាញ់ដល់ពួកគេដោយបង្គាប់ទៅតាមលទ្ធភាពដែលពួកគេអាចធ្វើបាន។

13 តើពួកអ្នកខ្លាចក្រីក្របូ នៅពេលដែលពួកអ្នកបរិច្ចាគមុននឹងពួកអ្នកពិភាក្សារឿងសម្ងាត់ជាមួយអ្នកនាំសារនោះ?ប្រសិនបើពួកអ្នកធ្វើមិនបាននូវអ្វីដែលអល់ឡោះបានប្រើនោះអល់ឡោះទ្រង់អនុញ្ញាតឱ្យពួកអ្នកអាចបោះបង់ការបរិច្ចាគនេះតែចូរពួកអ្នកត្រូវរក្សាឱ្យបានខ្ជាប់ខ្ជួនក្នុងការប្រតិបត្តិសឡាតបង់ហ្សាកាត់និងការប្រតិបត្តិចំពោះអល់ឡោះនិងរ៉ស៊ូលុលឡោះរបស់ទ្រង់។អល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្តគ្មានអ្វីអាចលាក់បាំងទ្រង់បានឡើយអំពីទង្វើរបស់ពួកអ្នក។ហើយទ្រង់ជាអ្នកតបស្នងឱ្យពួកអ្នកតាមអ្វីដែលបានប្រព្រឹត្ត។

أَلَمْ تَرَ إِلَى ٱلَّذِينَ تَوَلَّوْاْ قَوْمًا غَضِبَ ٱللَّهُ عَلَيْهِم مَّا هُم مِّنكُمْ وَلَا مِنْهُمْ وَيَحْلِفُونَ عَلَى ٱلْكَذِبِ وَهُمْ
يَعْلَمُونَ ﴿١٤﴾ أَعَدَّ ٱللَّهُ لَهُمْ عَذَابًا شَدِيدًا إِنَّهُمْ سَآءَ مَا كَانُواْ يَعْمَلُونَ ﴿١٥﴾ ٱتَّخَذُوٓاْ أَيْمَٰنَهُمْ
جُنَّةً فَصَدُّواْ عَن سَبِيلِ ٱللَّهِ فَلَهُمْ عَذَابٌ مُّهِينٌ ﴿١٦﴾ لَّن تُغْنِيَ عَنْهُمْ أَمْوَٰلُهُمْ وَلَآ أَوْلَٰدُهُم
مِّنَ ٱللَّهِ شَيْـًٔا أُوْلَٰٓئِكَ أَصْحَٰبُ ٱلنَّارِ هُمْ فِيهَا خَٰلِدُونَ ﴿١٧﴾ يَوْمَ يَبْعَثُهُمُ ٱللَّهُ جَمِيعًا فَيَحْلِفُونَ
لَهُۥ كَمَا يَحْلِفُونَ لَكُمْ وَيَحْسَبُونَ أَنَّهُمْ عَلَىٰ شَيْءٍ أَلَآ إِنَّهُمْ هُمُ ٱلْكَٰذِبُونَ ﴿١٨﴾ ٱسْتَحْوَذَ عَلَيْهِمُ
ٱلشَّيْطَٰنُ فَأَنسَىٰهُمْ ذِكْرَ ٱللَّهِ أُوْلَٰٓئِكَ حِزْبُ ٱلشَّيْطَٰنِ أَلَآ إِنَّ حِزْبَ ٱلشَّيْطَٰنِ هُمُ ٱلْخَٰسِرُونَ ﴿١٩﴾

14 តើអ្នក(មូហាំម៉ាត់)មិនបានឃើញពួកមូណាហ្វិគីន(ពួកពុតត្បុត)ដែលបានគាំទ្រក្រុម(យ៉ាហ៊ូទី)ដែលអល់ឡោះបានខឹងសម្បាចំពោះពួកគេដោយការប្រឆាំងនិងការប្រព្រឹត្តអាក្រក់របស់ពួកគេ។ពួកមូណាហ្វិគីនមិនមែនជាក្រុមរបស់ពួកអ្នកហើយក៏មិនមែនជាក្រុមរបស់ពួកយ៉ាហ៊ូតដែរ។ពួកគេនៅស្ទាក់ស្ទើរពាក់កណ្ដាលទីខាងក្រុមនេះក៏មិនមែនខាងក្រុមនោះក៏មិនមែន។ពួកគេស្បថថាពួកគេជាអ្នកមូស្លីមហើយពួកគេស្បថថាពួកគេពុំបាននាំដំណឹងទៅប្រាប់ពួកយ៉ាហ៊ូតទេ។តាមពិតពួកគេស្បថដោយភូតកុហក។

15 អល់ឡោះបានរៀបចំឱ្យពួកគេ( ពួកពុតត្បុត )នូវទារុណកម្មដ៏ធ្ងន់ធ្ងរបំផុតក្នុងថ្ងៃគីយ៉ាម៉ាត់។ដោយឱ្យពួកគេចូលឋាននរកជាន់ក្រោមបំផុត។ពិតណាស់ពួកគេបាន



ប្រព្រឹត្តនូវអំពើដ៏អាក្រក់។
16 ពួកគេបានយកការស្បថកុហករបស់ពួកគេធ្វើជាខែលការពារពីការសម្លាប់
ដោយសារភាពអជំនឿ( كفر )។ពួកគេបានបង្ហាញថាពួកគេជាជនម៉ូស្លីមគ្រាន់តែ
ដើម្បីការពារកូនចៅនិងទ្រព្យសម្បត្តិ របស់ពួកគេប៉ុណ្ណោះ។ពួកគេបានរារាំងអ្នកដទៃ
មិនឱ្យចូលឥស្លាមដោយមូលហេតុពួកគេមើលស្រាលកិច្ចការរបស់អ្នកម៉ូស្លីមនិង
បំបាក់ស្មារតីរបស់ពួកគេ។សម្រាប់ពួកគេទារុណកម្មដ៏គួរឱ្យអាម៉ាស់និងអាប់ឱន។
17 ទ្រព្យសម្បត្តិនិងកូនចៅរបស់ពួកគេនឹងមិនអាចការពារពួកគេពី( ទារុណកម្ម )អ
ល់ឡោះបានជាដាច់ខាត។ពួកទាំងនោះគឺជាពួកឋាននរកដោយពួកគេស្ថិតនៅក្នុង
នោះជាអមតៈដោយទារុណកម្មនៅតែបន្តរជានិច្ចគ្មានបញ្ចប់ឡើយ។
18 នៅថ្ងៃដែលអល់ឡោះនឹងធ្វើឱ្យពួកគេទាំងអស់គ្នារស់ឡើងវិញដោយគ្មាននរណា
ម្នាក់គេចផុតឡើយ។ពួកគេបានស្បថចំពោះអល់ឡោះថាពួកយើងពុំបានធ្វើអំពើបែប
នោះទេ។ពួកយើងគឺជាអ្នកមានជំនឿនិងប្រតិបត្តតាមអ្វីដែលអល់ឡោះអនុញ្ញាត។ពួក
គេស្បថកុហកនៅថ្ងៃគីយ៉ាម៉ាត់ដូចដែលពួកគេបានស្បថកុហកចំពោះពួកអ្នកកាល
នៅលោកិយដែរថាពួកគេជាជនម៉ូស្លីម។ហើយពួកគេនឹកស្មានថាពិតប្រាកដណាស់
នឹងការស្បថនេះពួកគេនឹងទទួលបានផលប្រយោជន៍ដូចនៅលោកិយដែរ។តាមពិត
ពួកគេគឺជាពួកភូតកុហកយ៉ាងពិតប្រាកដទាំងក្នុងលោកិយនិងថ្ងៃគីយ៉ាម៉ាត់។
19 ស្ហៃតនបានគ្រប់ដណ្តប់ទៅលើពួកគេនិងធ្វើឱ្យពួកគេភ្លេចភ្លាំងអំពីការរំលឹកអល់
ឡោះ។ពួកគេបោះបង់បទបញ្ញានិងការប្រតិបត្តិចំពោះទ្រង់។បែរជាប្រព្រឹត្តប្រការ
ដែលអល់ឡោះក្រោធខឹង។ពួកគេទាំងនោះជាទាហានរបស់ស្ហៃតននិងសាវ័ក របស់
វា។តើមិនមែនទេឬបក្សពួករបស់ស្ហៃតនគឺជាពួកដែលខាតបង់ទាំងនៅលោកិយនិង
ថ្ងៃគីយ៉ាម៉ាត់។ពិតណាស់ពួកគេបានលក់សេចក្តីចង្អុលបង្ហាញនឹងក្តីវង្វេងហើយលក់
ឋានសួគ៌នឹងឋាននរក។
20 ពិតប្រាកដណាស់ពួកដែលប្រឆាំងនឹងអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់( មូ
ហាំម៉ាត់ )នោះពួកទាំងនោះស្ថិតក្នុងចំណោមប្រជាជាតិដែលអល់ឡោះធ្វើឱ្យអាប់ឱន
ថោកទាបទាំងក្នុងលោកិយនិងបរលោក។

إِنَّ ٱلَّذِينَ يُحَآدُّونَ ٱللَّهَ وَرَسُولَهُۥٓ أُوْلَٰٓئِكَ فِي ٱلۡأَذَلِّينَ ٢٠ كَتَبَ ٱللَّهُ لَأَغۡلِبَنَّ أَنَا۠ وَرُسُلِيٓۚ
إِنَّ ٱللَّهَ قَوِيٌّ عَزِيزٞ ٢١ لَّا تَجِدُ قَوۡمٗا يُؤۡمِنُونَ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِ يُوَآدُّونَ مَنۡ
حَآدَّ ٱللَّهَ وَرَسُولَهُۥ وَلَوۡ كَانُوٓاْ ءَابَآءَهُمۡ أَوۡ أَبۡنَآءَهُمۡ أَوۡ إِخۡوَٰنَهُمۡ أَوۡ عَشِيرَتَهُمۡۚ
أُوْلَٰٓئِكَ كَتَبَ فِي قُلُوبِهِمُ ٱلۡإِيمَٰنَ وَأَيَّدَهُم بِرُوحٖ مِّنۡهُۖ وَيُدۡخِلُهُمۡ جَنَّٰتٖ تَجۡرِي
مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَاۚ رَضِيَ ٱللَّهُ عَنۡهُمۡ وَرَضُواْ عَنۡهُۚ أُوْلَٰٓئِكَ حِزۡبُ
ٱللَّهِۚ أَلَآ إِنَّ حِزۡبَ ٱللَّهِ هُمُ ٱلۡمُفۡلِحُونَ ٢٢

21 អល់ឡោះបានកត់ត្រារួចហើយ( នៅក្នុងឡាវហុលម៉ះហ្វ៊ូស )ថា៖យើងនិងអ្នកនាំ
សាររបស់យើងពិតជាឈ្នះលើសត្រូវដោយអំណាះអំណាងនិងអានុភាព។ពិត
ប្រាកដណាស់អល់ឡោះមហាខ្លាំងក្លាជួយដល់អ្នកនាំសាររបស់ទ្រង់។និងមហាខ្លាំង
ពូកែមានជ័យជំនះលើសត្រូវ។
22 អ្នក( មូហាំម៉ាត់ )នឹងមិនជួបប្រទះក្រុមដែលមានជំនឿលើអល់ឡោះនិងថ្ងៃ
បរលោកអាណិតស្រឡាញ់ពួកដែលប្រឆាំងនឹងអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់





ឡើយ។ទោះបីជាពួកដែលប្រឆាំងនឹងអល់ឡោះនោះគឺជាឪពុករបស់ពួកគេឬកូនៗរបស់ពួកគេឬបងប្អូនរបស់ពួកគេឬក្រុមគ្រួសាររបស់ពួកគេក៏ដោយ។ពីព្រោះការមានជំនឿវាបានរារាំងការគាំទ្រសត្រូវរបស់អល់ឡោះនិងអ្នកនាំសាររបស់ទ្រង់។ហើយចំណងជំនឿគឺវាខ្លាំងក្លាជាងចំណងអ្វីផ្សេងៗវាជាជំរើសដំបូងជានិច្ចនៅពេលដែលផ្ទុយគ្នា។ពួកគេនោះហើយជាអ្នកដែលមិនគាំទ្រសត្រូវអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ឡើយ។ទោះបីជាសាច់ញាតិរបស់ពួកគេក៏ដោយ។ពួកគេនោះហើយគឺជាអ្នកដែលអល់ឡោះបានចារទុកនូវភាពមានជំនឿនៅក្នុងដួងចិត្តរបស់ពួកគេដោយគ្មានកែប្រែ។ហើយបានឱ្យពួកគេមានភាពរឹងមាំកាន់តែខ្លាំងដោយភស្តុតាងនិងពន្លឺ។ហើយទ្រង់នឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវាដោយពួកគេនៅក្នុងនោះជាអមតៈជារៀងរហូតគ្មានទីបញ្ចប់ឡើយ។អល់ឡោះបានយល់ព្រមចំពោះពួកគេ។ហើយពួកគេក៏បានយល់ព្រមចំពោះទ្រង់វិញដែរនូវនៀកម៉ាត់ដែលទ្រង់បានផ្តល់ឱ្យ។ពួកគេគឺជាកងទ័ពរបស់ទ្រង់ដែលអនុវត្តតាមបទបញ្ជារបស់ទ្រង់ច្បាំងតស៊ូតទល់នឹងសត្រូវរបស់ទ្រង់ហើយពួកគេគាំទ្រពួកអ្នកដែលស្រឡាញ់គាំទ្រអល់ឡោះ។តើមិនមែនទេឬកងទ័ពរបស់អល់ឡោះគឺជាអ្នកដែលទទួលជោគជ័យ។ដោយទទួលបានសុភមង្គលនៅក្នុងលោកិយនិងនៅថ្ងៃបរលោក។

## អាល់ហាស្ហ៍រ

**គោលបំណងនៃស៊ូរ៉ោះ**បង្ហាញពីឧត្តមភាពនិងភាពខ្លាំងក្លារបស់អល់ឡោះដោយឱ្យពួកយ៉ាហ៊ូទនិងពួកម៉ូណាហ្វិកអន់ខ្សោយ។ហើយបង្ហាញពីការបែកបាក់របស់ពួកគេផ្ទុយពីការចុះសម្រុងគ្នារបស់អ្នកម៉ូស្លីម។

**តាហ្វសៀរ**

سَبَّحَ لِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلْأَرْضِ وَهُوَ ٱلْعَزِيزُ ٱلْحَكِيمُ ۝١ هُوَ ٱلَّذِيٓ أَخْرَجَ ٱلَّذِينَ
كَفَرُواْ مِنْ أَهْلِ ٱلْكِتَٰبِ مِن دِيَٰرِهِمْ لِأَوَّلِ ٱلْحَشْرِ مَا ظَنَنتُمْ أَن يَخْرُجُواْ وَظَنُّوٓاْ أَنَّهُم
مَّانِعَتُهُمْ حُصُونُهُم مِّنَ ٱللَّهِ فَأَتَىٰهُمُ ٱللَّهُ مِنْ حَيْثُ لَمْ يَحْتَسِبُواْ وَقَذَفَ فِي قُلُوبِهِمُ
ٱلرُّعْبَ يُخْرِبُونَ بُيُوتَهُم بِأَيْدِيهِمْ وَأَيْدِي ٱلْمُؤْمِنِينَ فَٱعْتَبِرُواْ يَٰٓأُوْلِي ٱلْأَبْصَٰرِ ۝٢ وَلَوْلَآ
أَن كَتَبَ ٱللَّهُ عَلَيْهِمُ ٱلْجَلَآءَ لَعَذَّبَهُمْ فِي ٱلدُّنْيَا وَلَهُمْ فِي ٱلْأٓخِرَةِ عَذَابُ ٱلنَّارِ ۝٣
ذَٰلِكَ بِأَنَّهُمْ شَآقُّواْ ٱللَّهَ وَرَسُولَهُۥ وَمَن يُشَآقِّ ٱللَّهَ فَإِنَّ ٱللَّهَ شَدِيدُ ٱلْعِقَابِ ۝٤ مَا قَطَعْتُم
مِّن لِّينَةٍ أَوْ تَرَكْتُمُوهَا قَآئِمَةً عَلَىٰٓ أُصُولِهَا فَبِإِذْنِ ٱللَّهِ وَلِيُخْزِيَ ٱلْفَٰسِقِينَ ۝٥

(1) អ្វីៗដែលមាននៅលើមេឃជាច្រើនជាន់និងអ្វីៗដែលមាននៅលើផែនដីទាំងអស់បានលើកតម្កើងចំពោះអល់ឡោះ។ហើយទ្រង់មហាខ្លាំងពូកែគ្មានអ្វីមួយខ្លាំងក្លាជាងទ្រង់ឡើយ។ហើយទ្រង់មហាគតិបណ្ឌិតលើអ្វីៗទាំងអស់។

(2) ទ្រង់ជាអ្នកបណ្តេញអំបូរណាឌៀរដែលបានប្រឆាំងនឹងអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ចេញពីលំនៅដ្ឋានរបស់ពួកគេដែលជាការចាកចេញដំបូងបង្អស់របស់ពួកគេពីម៉ាឌីណះទៅស្ហាម។ហើយពួកគេជាក្រុមយ៉ាហ៊ូទនៃគីតាប់តៅរ៉ោះ។បន្ទាប់ពីពួកគេបានក្បត់កិច្ចសន្យារបស់ពួកគេ។ហើយពួកគេបានក្លាយជាសម្ពន្ធមិត្តរបស់ពួកមូស្ហរីគីនប្រឆាំងនឹងណាពី។គេក៏បានបណ្តេញពួកគេទៅទឹកដីស្ហាម។ពួកអ្នក(ពួកម៉ូស្លីម)មិនបានគិតថាពួកគេ(យ៉ាហ៊ូទី)នឹងចាកចោលផ្ទះសម្បែងរបស់ពួកគេដោយសារតស្សរភាពសក្តានុភាពនិងសុវត្ថិភាពដ៏រឹងមាំរបស់ពួកគេ។ហើយពួកគេបានគិតថាពិត



ប្រាកដណាស់បន្ទាយដ៏រឹងមាំរបស់ពួកគេអាចការពារពួកគេពី( ទារុណកម្ម )អល់ឡោះបាន។ប៉ុន្តែអល់ឡោះបានផ្តល់វាឱ្យពួកគេខណៈដែលពួកគេនឹកស្មានមិនដល់។ដោយអល់ឡោះបានបញ្ជាណាពីរបស់ទ្រង់ឱ្យច្បាំងតស៊ូប្រឆាំងនឹងពួកគេនិរទេសពួកគេចេញពីផ្ទះសំបែង។ហើយទ្រង់បានបញ្ចូលការភ័យខ្លាចទៅក្នុងចិត្តរបស់ពួកគេខណៈដែលពួកគេបំផ្លាញលំនៅដ្ឋានរបស់ពួកគេដោយដៃពួកគេផ្ទាល់ពីខាងក្នុងដើម្បីកុំឱ្យអ្នកមានជំនឿទទួលបានប្រយោជន៍។ហើយអ្នកមានជំនឿបានបំផ្លាញវាពីខាងក្រៅ។ដូច្នេះ ចូរពិចារណាចុះឱបណ្ដាអ្នកដែលមានការឈ្វេងយល់នូវលទ្ធផលដែលពួកគេបានប្រឆាំងចូរពួកអ្នកកុំធ្វើដូចពួកគេមិនដូច្នេះទេពួកអ្នកនឹងទទួលនូវទារុណកម្មដូចអ្វីដែលពួកគេទទួលអញ្ចឹង។

3 ហើយប្រសិនបើអល់ឡោះមិនបានដាក់បញ្ញាលើពួកគេឱ្យចាកចេញពីលំនៅដ្ឋានរបស់ពួកគេទេនោះទ្រង់ពិតជានឹងធ្វើទារុណកម្មពួកគេ ដោយសម្លាប់និងចាប់ជាឈ្លើយសឹកនៅក្នុងលោកិយនេះដូចទ្រង់បានធ្វើចំពោះពួកកុលសម្ព័ន្ធគូរ៉យហ្ស៍ហ្រ្វាះជាមិនខាន។ ហើយនៅ ថ្ងៃបរលោកវិញ ពួកគេនឹងទទួលទារុណកម្មនៃភ្លើងនរកដែលកំពុងតែចាំពួកគេជារៀងរហូត។

4 អ្វីៗដែលបានកើតឡើងនេះដោយសារតែពួកគេចងសត្រូវជាមួយនឹងអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ហើយពួកគេបានក្បត់នឹងកិច្ចសន្យា។ហើយអ្នកណាដែលប្រឆាំងនឹងអល់ឡោះពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកដាក់ទណ្ឌកម្មដ៏ធ្ងន់ធ្ងរបំផុត។ពួកគេសក្ដិសមនឹងទទួលទណ្ឌកម្ម។

5 ដើមល្មើដែលពួកអ្នក( អ្នកមូស្លីម )បានកាប់រំលំដើម្បីកំញើញពួកអ្នកដែលប្រឆាំងនៅក្នុងសង្គ្រាមអំបូរណាឌៀរឬក៏ពួកអ្នកទុកវាឱ្យឈរនៅលើគល់របស់វាដើម្បីទទួលយកផលប្រយោជន៍គឺជាការអនុញ្ញាតរបស់អល់ឡោះ។វាមិនមែនជាការបំផ្លិចបំផ្លាញផែនដីដូចពួកគេចោទនោះទេ។ទ្រង់ធ្វើឱ្យពួកអ្នកដែលល្មើសមិនប្រតិបត្តិនោះត្រូវអាម៉ាស់ អាប់ឱនគឺពួកយ៉ាហ៊ូតដែលក្បត់កិច្ចសន្យា។

وَمَآ أَفَآءَ ٱللَّهُ عَلَىٰ رَسُولِهِۦ مِنۡهُمۡ فَمَآ أَوۡجَفۡتُمۡ عَلَيۡهِ مِنۡ خَيۡلٖ وَلَا رِكَابٖ وَلَٰكِنَّ ٱللَّهَ يُسَلِّطُ رُسُلَهُۥ عَلَىٰ مَن يَشَآءُۚ وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ قَدِيرٞ ٦

مَّآ أَفَآءَ ٱللَّهُ عَلَىٰ رَسُولِهِۦ مِنۡ أَهۡلِ ٱلۡقُرَىٰ فَلِلَّهِ وَلِلرَّسُولِ وَلِذِي ٱلۡقُرۡبَىٰ وَٱلۡيَتَٰمَىٰ وَٱلۡمَسَٰكِينِ وَٱبۡنِ ٱلسَّبِيلِ كَيۡ لَا يَكُونَ دُولَةَۢ بَيۡنَ ٱلۡأَغۡنِيَآءِ مِنكُمۡۚ وَمَآ ءَاتَىٰكُمُ ٱلرَّسُولُ فَخُذُوهُ وَمَا نَهَىٰكُمۡ عَنۡهُ فَٱنتَهُواْۚ وَٱتَّقُواْ ٱللَّهَۖ إِنَّ ٱللَّهَ شَدِيدُ ٱلۡعِقَابِ ٧

6 ហើយអ្វីៗដែលអល់ឡោះបានប្រទានជាជ័យភណ្ឌឱ្យអ្នកនាំសាររបស់ទ្រង់អំពី( ទ្រព្យសម្បត្តិ )ពួកគេនោះគឺពួកអ្នកមិនបានចំណាយសេះមួយក្បាល ឬសត្វអូដ្ឋមួយក្បាលសម្រាប់ជិះយកទៅច្បាំងហើយពួកអ្នកមិនបាច់រងទុក្ខលំបាកឡើយ។ប៉ុន្តែអល់ឡោះផ្តល់អានុភាពដល់បណ្តាអ្នកនាំសាររបស់ទ្រង់ទៅលើអ្នកណាដែលទ្រង់មានចេតនា។ហើយទ្រង់បានផ្តល់អានុភាពដល់អ្នកនាំសាររបស់ទ្រង់ទៅលើអំបូរណាឌៀរហើយបានយកឈ្នះដោយមិនចាំបាច់ធ្វើសង្គ្រាម។ពិតប្រាកដណាស់អល់ឡោះខ្លាំងពូកែលើសអ្វីទាំងអស់។គ្មានអ្វីយកឈ្នះទ្រង់បានឡើយ។

7 អ្វីៗដែលអល់ឡោះប្រទានជាជ័យភណ្ឌឱ្យអ្នកនាំសាររបស់ទ្រង់ដែលជាទ្រព្យសម្បត្តិរបស់អ្នកភូមិស្រុក( ពួកមូស្ហរីគីន )នោះគឺសម្រាប់អល់ឡោះ។ទ្រង់សម្រេចក្នុងរឿងនេះតាមតែទ្រង់សព្វព្រះទៅតាមអ្វីដែលទ្រង់ចង់។និងសម្រាប់អ្នកនាំសារជាកម្មសិទ្ធិ





របស់រ៉ស៊ូលុលឡោះ។និងសម្រាប់សាច់ញាតិ របស់អ្នកនាំសារត្រកូលហាស្ស៊ីមនិងត្រកូលមុត្តាល់ីប។ពីព្រោះគេហាមពួកគេមិនឱ្យទទួលយកទ្រព្យបរិច្ចាគ។និងក្មេងកំព្រា និងអ្នកក្រីក្រហើយនិងអ្នកធ្វើដំណើរដាច់ស្បៀង។ដើម្បីកុំឱ្យទ្រព្យសម្បត្តិនោះស្ថិតក្នុងកណ្ដាប់ដៃអ្នកមានណាម្នាក់ក្នុងចំណោមពួកអ្នក។ហើយអ្វីដែលអ្នកនាំសារបានផ្ដល់ឱ្យពួកអ្នក។ចូរពួកអ្នកទទួលយកវាចុះ។ហើយអ្វីដែលគាត់បានហាមឃាត់ពួកអ្នកអំពីវា ចូរពួកអ្នកបោះបង់ចោលចុះ។ចូរពួកអ្នកកោតខ្លាចអល់ឡោះដោយអនុវត្តតាមបទបញ្ជារបស់ទ្រង់និងជៀសវាងពីការហាមឃាត់របស់ទ្រង់។ពិតប្រាកដណាស់ អល់ឡោះគឺជាអ្នកដាក់ទណ្ឌកម្មដ៏ធ្ងន់ធ្ងរបំផុតចូរប្រុងប្រយ័ត្នទណ្ឌកម្មរបស់ទ្រង់។

لِلْفُقَرَآءِ ٱلْمُهَـٰجِرِينَ ٱلَّذِينَ أُخْرِجُوا۟ مِن دِيَـٰرِهِمْ وَأَمْوَٰلِهِمْ يَبْتَغُونَ فَضْلًا مِّنَ ٱللَّهِ
وَرِضْوَٰنًا وَيَنصُرُونَ ٱللَّهَ وَرَسُولَهُۥٓ ۚ أُو۟لَـٰٓئِكَ هُمُ ٱلصَّـٰدِقُونَ ﴿٨﴾

(8) គេបានចែកមួយចំណែកដល់ពួកអ្នកក្រដែលភៀសខ្លួនលើផ្លូវអល់ឡោះ។ដែលពួកគេត្រូវបង្ខំចិត្តចាកចោលទ្រព្យសម្បត្តិនិងកូនចៅរបស់ពួកគេ។ខណៈដែលពួកគេស្វែងរកការប្រោសប្រទាននៅលើលោកិយនិងការយល់ព្រមពីអល់ឡោះនៅថ្ងៃបរលោក។ថែមទាំងពួកគេបានជួយ( សាសនារបស់ )អល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ដោយពលីជីវិតធ្វើសង្គ្រាមក្នុងផ្លូវអល់ឡោះ។ពួកគេគឺជាពួកអ្នកស្មោះត្រង់អ្នកដែលមានជំហររឹងមាំ។

**នៅពេលដែលអល់ឡោះបានរំលឹកនិងកោតសរសើរដល់អ្នកភៀសខ្លួន( មូហាជីរីន ) អល់ឡោះក៏បានរំលឹកនិងកោតសរសើរដល់អ្នកម៉ាឌីណះ(អានសរ)ផងដែរ។អល់ឡោះបានមានបន្ទូលថា៖**

وَٱلَّذِينَ تَبَوَّءُو ٱلدَّارَ وَٱلْإِيمَـٰنَ مِن قَبْلِهِمْ يُحِبُّونَ مَنْ هَاجَرَ إِلَيْهِمْ وَلَا يَجِدُونَ فِى
صُدُورِهِمْ حَاجَةً مِّمَّآ أُوتُوا۟ وَيُؤْثِرُونَ عَلَىٰٓ أَنفُسِهِمْ وَلَوْ كَانَ بِهِمْ خَصَاصَةٌ ۚ وَمَن
يُوقَ شُحَّ نَفْسِهِۦ فَأُو۟لَـٰٓئِكَ هُمُ ٱلْمُفْلِحُونَ ﴿٩﴾ وَٱلَّذِينَ جَآءُو مِنۢ بَعْدِهِمْ
يَقُولُونَ رَبَّنَا ٱغْفِرْ لَنَا وَلِإِخْوَٰنِنَا ٱلَّذِينَ سَبَقُونَا بِٱلْإِيمَـٰنِ وَلَا تَجْعَلْ فِى قُلُوبِنَا
غِلًّا لِّلَّذِينَ ءَامَنُوا۟ رَبَّنَآ إِنَّكَ رَءُوفٌ رَّحِيمٌ ﴿١٠﴾

(9) ហើយបណ្ដាអ្នកដែលរស់នៅទីក្រុងម៉ាឌីណះមុនការភៀសខ្លួននោះនិងមានជំនឿចំពោះអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់គឺពួកគេ( អានសរ )ស្រឡាញ់អ្នកដែលបានភៀសខ្លួនពីម៉ាក្កះទៅកាន់ពួកគេ។ហើយនៅក្នុងចិត្តរបស់ពួកគេគ្មានភាពច្រណែនឈ្នានីសអំពីអ្វីៗដែលគេបានផ្ដល់ឱ្យពួកគេ( មូហាជីរីន )ឡើយ។ថែមទាំងពួកគេគិតគូរ( ពួកមូហាជីរីន )ជាងខ្លួនឯងទៅទៀតទោះបីជាពួកគេពួកគេក្រីក្រខ្វះខាតឬត្រូវការចាំបាច់យ៉ាងណាក៏ដោយ។ហើយអ្នកណាដែលត្រូវគេរក្សាឱ្យផុតពីភាពកំណាញ់ចំពោះខ្លួនគេនោះពួកទាំងនោះគឺជាពួកដែលទទួលបានជោគជ័យ។

(10) ពួកអ្នកជំនាន់ក្រោយដែលកាន់តាមពួកគេបានយ៉ាងល្អឥតខ្ចោះរហូតដល់ថ្ងៃបរលោក។ពួកគេបានបួងសួងសុំថាៈឱម្ចាស់របស់ពួកយើង!សូមទ្រង់មេត្តាអភ័យទោសឱ្យពួកយើងនិងបងប្អូនរបស់ពួកយើងពីមុនៗដែលមានជំនឿចំពោះអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ផង។ហើយសូមទ្រង់មេត្តាកុំធ្វើឱ្យចិត្តរបស់ពួកយើងមានភាពច្រណែនឈ្នានីសចំពោះបណ្ដាអ្នកដែលមានជំនឿអ្វីៗឱម្ចាស់របស់ពួកយើង!ពិតប្រាកដណាស់អល់ឡោះមហាមេត្តាករុណាមហាអាណិតស្រឡាញ់។



أَلَمْ تَرَ إِلَى ٱلَّذِينَ نَافَقُوا۟ يَقُولُونَ لِإِخْوَٰنِهِمُ ٱلَّذِينَ كَفَرُوا۟ مِنْ أَهْلِ ٱلْكِتَٰبِ لَئِنْ
أُخْرِجْتُمْ لَنَخْرُجَنَّ مَعَكُمْ وَلَا نُطِيعُ فِيكُمْ أَحَدًا أَبَدًا وَإِن قُوتِلْتُمْ لَنَنصُرَنَّكُمْ
وَٱللَّهُ يَشْهَدُ إِنَّهُمْ لَكَٰذِبُونَ ١١ لَئِنْ أُخْرِجُوا۟ لَا يَخْرُجُونَ مَعَهُمْ وَلَئِن قُوتِلُوا۟ لَا
يَنصُرُونَهُمْ وَلَئِن نَّصَرُوهُمْ لَيُوَلُّنَّ ٱلْأَدْبَٰرَ ثُمَّ لَا يُنصَرُونَ ١٢
لَأَنتُمْ أَشَدُّ رَهْبَةً فِى صُدُورِهِم مِّنَ ٱللَّهِ ذَٰلِكَ بِأَنَّهُمْ قَوْمٌ لَّا يَفْقَهُونَ ١٣
لَا يُقَٰتِلُونَكُمْ جَمِيعًا إِلَّا فِى قُرًى مُّحَصَّنَةٍ أَوْ مِن وَرَآءِ جُدُرٍۭ بَأْسُهُم بَيْنَهُمْ شَدِيدٌ
تَحْسَبُهُمْ جَمِيعًا وَقُلُوبُهُمْ شَتَّىٰ ذَٰلِكَ بِأَنَّهُمْ قَوْمٌ لَّا يَعْقِلُونَ ١٤ كَمَثَلِ ٱلَّذِينَ
مِن قَبْلِهِمْ قَرِيبًا ذَاقُوا۟ وَبَالَ أَمْرِهِمْ وَلَهُمْ عَذَابٌ أَلِيمٌ ١٥ كَمَثَلِ ٱلشَّيْطَٰنِ إِذْ قَالَ
لِلْإِنسَٰنِ ٱكْفُرْ فَلَمَّا كَفَرَ قَالَ إِنِّى بَرِىٓءٌ مِّنكَ إِنِّىٓ أَخَافُ ٱللَّهَ رَبَّ ٱلْعَٰلَمِينَ ١٦
فَكَانَ عَٰقِبَتَهُمَآ أَنَّهُمَا فِى ٱلنَّارِ خَٰلِدَيْنِ فِيهَا وَذَٰلِكَ جَزَٰٓؤُا۟ ٱلظَّٰلِمِينَ ١٧

11 តើអ្នក(មូហាំម៉ាត់)មិនបានមើលទេឬ?ចំពោះពួកពុតត្បុតដែលលាក់បាំងការប្រឆាំងនិងបង្ហាញថាខ្លួនជាអ្នកមានជំនឿដែលនិយាយទៅកាន់បងប្អូនរបស់ពួកគេដែលបានប្រឆាំងក្នុងចំណោមពួកអះលីគីតាប(យ៉ាហ៊ូទីនៃអំបូរណាឌៀរ)ថាៈ ចូរពួកអ្នកប្រកាន់ជំហររឹងមាំប្រកែកកុំចុះចាញ់។ពីព្រោះពួកយើងមិនដោះដៃចេញពីពួកអ្នកទេ។ប្រសិនបើពួកអ្នកត្រូវពួកម៉ូស្លីមបណ្តេញចេញយើងពិតជានឹងចាកចេញជាមួយពួកអ្នកដែរ។ហើយយើងមិនធ្វើតាមអ្នកដែលហាមឃាត់យើងមិនឱ្យចេញជាមួយពួកអ្នកជាដាច់ខាត។បើសិនពួកអ្នកត្រូវធ្វើសង្គ្រាមពួកយើងនឹងចូលរួមជាមួយនឹងពួកអ្នកធ្វើសង្គ្រាម។ហើយអល់ឡោះជាអ្នកធ្វើសាក្សីថាពិតប្រាកដណាស់ពួកគេគឺជាពួកភូតកុហកលើអ្វីដែលពួកគេបាននិយាយថាពួកគេនិងចាកចេញប្រសិនបើពួកយ៉ាហ៊ូទត្រូវចាកចេញ។ហើយពួកគេនឹងជួយប្រសិនបើពួកយ៉ាហ៊ូទត្រូវធ្វើសង្គ្រាម។

12 បើសិនជាអ្នកម៉ូស្លីមជម្លៀសពួកយ៉ាហ៊ូទពួកគេមិនព្រមទៅជាមួយឡើយ។ហើយបើសិនជាត្រូវធ្វើសង្គ្រាមពួកគេនឹងមិនមកជួយនោះទេ។បើសិនជាពួកទៅជួយក៏បរាជ័យដែរ។បន្ទាប់ពីនោះពួកមូណាហ្វីគីនមិនបានទទួលជោគជ័យនោះទេ។ មិនត្រឹមតែប៉ុណ្ណោះអល់ឡោះធ្វើឱ្យពួកគេអាប់ឱនហើយអំពើពុតត្បុតរបស់ពួកគេមិនអាចជួយជាប្រយោជន៍ដល់ពួកគេជាដាច់ខាត។

13 នែពួកអ្នកម៉ូស្លីមទាំងឡាយ!ក្នុងចិត្តរបស់ពួកមូណាហ្វីគីនឬពួកយ៉ាហ៊ូតភ័យខ្លាចពួកអ្នកខ្លាំងជាងខ្លាចអល់ឡោះ។នេះដោយសារពួកគេជាមនុស្សដែលខ្វះវិចារណញ្ញាណ។បើសិនជាពួកគេមានវិចារណញ្ញាណពួកគេច្បាស់ជាដឹងថាអល់ឡោះជាអ្នកដែលពួកគេត្រូវភ័យខ្លាចព្រោះទ្រង់ជាអ្នកបញ្ជូនពួកអ្នកម៉ូស្លីមឱ្យមកត្រួតត្រាលើពួកគេ។

14 ពួកយ៉ាហ៊ូទមិនហ៊ាននាំគ្នាមកទាំងហ្វូងធ្វើសង្គ្រាមទល់មុខគ្នាជាមួយនឹងពួកអ្នក(អ្នកម៉ូស្លីម)ទេ។លើកលែងតែនៅក្នុងក្រុងដែលមានកំផែងបិទជិត។
ឬនៅពួនពីក្រោយជញ្ជាំងដោយសារការសំសាក និងភាពភ័យខ្លាចរបស់ពួកគេ។ពួកគេខ្លាំងប្រចេងប្រចាងតែជាមួយគ្នាឯង។ពួកអ្នកគិតស្មានថាពួកគេរួមគ្នាតែមួយតាមពិតចិត្តរបស់ពួកគេផ្សេងៗគ្នា។ពួកគេរួបរួមគ្នាតែសម្បកក្រៅ។ប៉ុន្តែក្នុងដួងចិត្តរបស់ពួកគេគិតផ្សេងគ្នាមានបំណងផ្សេងគ្នា។នេះដោយសារតែពួកគេខ្វះវិចារណញ្ញាណ។បើសិនជាពួកគេមានវិចារណញ្ញាណពួកគេច្បាស់ជាស្គាល់ការពិតនាំគ្នាប្រតិបត្តិតាម





**ហើយពួកគេរួមគ្នាលែងមានទំនាស់នឹងគ្នា។**

(15) ពួកយ៉ាហ៊ូទបានទទួលរងគ្រោះដោយការអជំនឿរបស់ពួកគេប្រៀបដូចជាពួកមុស្ហរីគីនមីក្កះមុនពួកគេបន្តិច។ ពួកគេបានភ្លក្សនូវលទ្ធផលចុងក្រោយរបស់ពួកគេដ៏អាក្រក់។ លទ្ធផលចុងក្រោយដ៏អាក្រក់នៃភាពអជំនឿរបស់ពួកគេនៅក្នុងលោកីយ៍នេះត្រូវស្លាប់និងត្រូវចាប់ជាឈ្លើយសឹកក្នុងសមរភូមិបាឌើរ។ហើយនៅថ្ងៃគីយ៉ាម៉ះពួកគេនឹងទទួលទារុណកម្មយ៉ាងខ្លោចផ្សា។

(16) ការក្បត់និងការដោះដៃរបស់ពួកគេប្រៀបដូចជាស្ហៃតនចំពោះមនុស្ស។គេបោកបញ្ឆោតឱ្យមនុស្សក្បត់នឹងអល់ឡោះ ល្បួងគេ និងជំរុញគេឱ្យក្បត់។ លុះដល់ពេលមនុស្សព្រមក្បត់តាមខ្លួនហើយស្ហៃតនបាននិយាយថាខ្ញុំគ្មានអ្វីពាក់ព័ន្ធនឹងអ្នកទេ។ ប្រាកដណាស់ ខ្ញុំខ្លាចអល់ឡោះជាម្ចាស់នៃសកលលោក។ ជាលេសដែលស្ហៃតននិយាយដោះសារជាមួយនឹងមនុស្ស។

(17) លទ្ធផលចុងក្រោយនៃទង្វើរបស់ស្ហៃតននិងអ្នកតាមវា(ស្ហៃតនអ្នកដែលត្រូវគេធ្វើតាម។មនុស្សជាអ្នកធ្វើតាម)នៅថ្ងៃគីយ៉ាម៉ះគឺស្ថិតក្នុងឋាននរកជាអមតៈ។នោះហើយគឺជាការតបស្នងរបស់ពួកដែលបំពាន។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ وَلۡتَنظُرۡ نَفۡسٞ مَّا قَدَّمَتۡ لِغَدٖۖ وَٱتَّقُواْ ٱللَّهَۚ إِنَّ ٱللَّهَ خَبِيرُۢ
بِمَا تَعۡمَلُونَ ١٨ وَلَا تَكُونُواْ كَٱلَّذِينَ نَسُواْ ٱللَّهَ فَأَنسَىٰهُمۡ أَنفُسَهُمۡۚ أُوْلَٰٓئِكَ هُمُ ٱلۡفَٰسِقُونَ
١٩ لَا يَسۡتَوِيٓ أَصۡحَٰبُ ٱلنَّارِ وَأَصۡحَٰبُ ٱلۡجَنَّةِۚ أَصۡحَٰبُ ٱلۡجَنَّةِ هُمُ ٱلۡفَآئِزُونَ ٢٠

(18) ឱបណ្តាអ្នកដែលមានជំនឿ!ចូរពួកអ្នកប្រព្រឹត្តទង្វើរណាដែលគេបានកំណត់លើពួកអ្នក។ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះដោយអនុវត្តនូវអ្វីដែលទ្រង់បានបញ្ជារប្រើនិងជៀសឱ្យឆ្ងាយនូវអ្វីដែលទ្រង់ហាមឃាត់។ចូរគិតពិចារណាចំពោះទង្វើណាមួយដែលខ្លួនប្រតិបត្តិទុកសម្រាប់ថ្ងៃបរលោក។ចូរកោតខ្លាចអល់ឡោះពិតណាស់អល់ឡោះជ្រៀតជ្រាបនូវអ្វីដែលពួកអ្នកបានធ្វើគ្មានអ្វីអាចលាក់បាំងទ្រង់បានឡើយ។ហើយទ្រង់នឹងតបស្នងដល់អ្នកនូវអ្វីដែលអ្នកបានប្រព្រឹត្ត។

(19) ហើយចូរពួកអ្នក(អ្នកមានជំនឿ)កុំធ្វើដូចពួកដែលបានភ្លេចអល់ឡោះដោយមិនអនុវត្តនូវអ្វីដែលទ្រង់បានបញ្ជារប្រើនិងមិនជៀសឱ្យឆ្ងាយនូវអ្វីដែលទ្រង់ហាមឃាត់។ទ្រង់ធ្វើឱ្យពួកគេភ្លេចខ្លួនឯងដូចជាពួកគេភ្លេចទ្រង់ដែរ។ហើយពួកគេមិនបានប្រព្រឹត្តទង្វើដែលនាំឱ្យចាកឆ្ងាយពីការខឹងសម្បារនិងទារុណកម្មរបស់អល់ឡោះ។ពួកគេនោះហើយគឺជាពួកដែលបានភ្លេចអល់ឡោះដោយមិនអនុវត្តនូវអ្វីដែលទ្រង់បានបញ្ជារប្រើនិងមិនជៀសឱ្យឆ្ងាយនូវអ្វីដែលទ្រង់ហាមឃាត់។ហើយពួកគេចាកឆ្ងាយពីការអនុវត្តតាមបទបញ្ជារអល់ឡោះ។

(20) ពួកឋាននរកនិងបណ្តាអ្នកឋានសួគ៌មិនស្មើគ្នាឡើយ។ពួកគេខុសប្លែកពីគ្នាដូចជាទង្វើរបស់ពួកគេខុសគ្នាដែរពេលនៅលើលោកិយ៍។បណ្តាអ្នកឋានសួគ៌គឺជាអ្នកដែលទទួលបានជោគជ័យក្នុងការបំពេញកាតព្វកិច្ចហើយរួចផុតពីប្រការទាំងឡាយដែលគេស្អប់ខ្ពើម។

لَوۡ أَنزَلۡنَا هَٰذَا ٱلۡقُرۡءَانَ عَلَىٰ جَبَلٖ لَّرَأَيۡتَهُۥ خَٰشِعٗا مُّتَصَدِّعٗا مِّنۡ خَشۡيَةِ ٱللَّهِۚ وَتِلۡكَ
ٱلۡأَمۡثَٰلُ نَضۡرِبُهَا لِلنَّاسِ لَعَلَّهُمۡ يَتَفَكَّرُونَ ٢١ هُوَ ٱللَّهُ ٱلَّذِي لَآ إِلَٰهَ إِلَّا هُوَۖ
عَٰلِمُ ٱلۡغَيۡبِ وَٱلشَّهَٰدَةِۖ هُوَ ٱلرَّحۡمَٰنُ ٱلرَّحِيمُ ٢٢ هُوَ ٱللَّهُ ٱلَّذِي لَآ إِلَٰهَ إِلَّا هُوَ
ٱلۡمَلِكُ ٱلۡقُدُّوسُ ٱلسَّلَٰمُ ٱلۡمُؤۡمِنُ ٱلۡمُهَيۡمِنُ ٱلۡعَزِيزُ ٱلۡجَبَّارُ ٱلۡمُتَكَبِّرُۚ سُبۡحَٰنَ



ٱللَّهِ عَمَّا يُشۡرِكُونَ ﴿٢٣﴾ هُوَ ٱللَّهُ ٱلۡخَٰلِقُ ٱلۡبَارِئُ ٱلۡمُصَوِّرُۖ لَهُ ٱلۡأَسۡمَآءُ
ٱلۡحُسۡنَىٰۚ يُسَبِّحُ لَهُۥ مَا فِي ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۖ وَهُوَ ٱلۡعَزِيزُ ٱلۡحَكِيمُ ﴿٢٤﴾

21 ប្រសិនបើយើងបញ្ចុះគម្ពីរគួរអាននេះទៅលើភ្នំណាមួយអ្នក(អ្នកមានជំនឿ)ពិត
ជានឹងឃើញភ្នំនោះឱនលំទោនរហូតដល់បែកជាបំណែកដោយសារខ្លាចអល់ឡោះ។
ដោយខ្លឹមសារគម្ពីរអាល់គួរអានដែលក្តោបលើពាក្យទូន្មានដែលធ្វើឱ្យដួងចិត្ត
ទន់ភ្លន់និងការព្រមានយ៉ាងធ្ងន់ធ្ងរ។ឧទាហរណ៍នេះយើងលើកឡើងសម្រាប់មនុស្ស
សង្ឃឹមថាពួកគេចេះគិតពិចារណា។ពិចារណាលើអ្វីដែលចាំបាច់លើពួកគេដើម្បីឱ្យ
ពួកគេទទួលយកជាមេរៀននិងបង្ការខ្លួន។
22 23 ទ្រង់គឺអល់ឡោះជាម្ចាស់ដែលគ្មានម្ចាស់ណាត្រូវគេគោរពសក្ការៈដ៏ពិត
ប្រាកដក្រៅពីទ្រង់ឡើយ។
**ទ្រង់មហាដឹងនូវអ្វីដែលលាក់កំបាំងនិងអ្វីដែលលាតត្រដាង។គ្មានអ្វីអាចលាក់បាំង
ទ្រង់បានឡើយ។មេត្តាករុណាទាំងនៅលើកិយនិងថ្ងៃគីយ៉ាម៉ាត់។ក្តីមេត្តារបស់ទ្រង់
រីកសាយដល់សត្វលោកទាំងអស់។ទ្រង់ជាស្តេចគ្រប់គ្រងនិងស្អាតស្អំពីរាល់ភាពអាប់
ឱននិងភាពខ្វះខាត។ទ្រង់ជាអ្នកដែលបានស្រទាននូវសេចក្តីសុខសន្តិភាពដល់ខ្ញុំបម្រើ
របស់ទ្រង់។រួចផុតពីភាពអយុត្តិធម៌។ទ្រង់ជាអ្នកបញ្ជាក់ពីស្ថភាពរបស់ពួករ៉ស៊ូលុល
ឡោះរបស់ទ្រង់ដោយបង្ហាញនូវអច្ឆរិយភាពទាំងឡាយ( المعجزات )។ទ្រង់ជាសាក្សីលើ
ខ្ញុំបម្រើតាមរយៈទង្វើរបស់ពួកគេ។ទ្រង់ឃ្លាំមើលទង្វើរបស់ពួកគេ។ទ្រង់មានអំណាច
ឈ្នះអស់អ្វីៗទាំងពួងគ្មានអ្វីផ្ចាញ់ទ្រង់ឡើយ។អានុភាពរបស់អល់ឡោះខ្ពង់ខ្ពស់។
អំណាចដែលគ្មាននរណាមានលទ្ធភាពឈានទៅដល់។ទ្រង់ក្រអឺតសុក្រឹតតែតខ្ពោះថ្កុំ
ថ្កើងជ្រះស្អាតពីអ្វីដែលមិនសក្តិសមនឹងទ្រង់។**
24 អល់ឡោះជាអ្នកបង្កើតទ្រង់បានបង្កើតអ្វីៗទាំងអស់។ទ្រង់ជាអ្នកបង្កើតជាអ្នក
ប្រឌិតឱ្យកើតឡើងនូវអ្វីសព្វបែបយ៉ាង។ទ្រង់ជាអ្នកដែលសូន្យរូបផ្គុំរូបឱ្យមានទម្រង់
ខុសៗគ្នាទៅតាមអ្វីដែលទ្រង់ពេញចិត្ត។ទ្រង់មាននាមនិងលក្ខណៈសម្បត្តិជាច្រើនដ៏
ល្អប្រពៃនិងខ្ពង់ខ្ពស់។អ្វីៗនៅលើមេឃជាច្រើនជាន់ និងផែនដីលើកតម្កើងទ្រង់។
ហើយទ្រង់មហាខ្លាំងពូកែមហាគតិបណ្ឌិត។

## អាល់មុមតាហុ◌ីណះ

**គោលបំណងនៃស៊ូរ៉ោះ**ការជម្រះចិត្តរបស់អ្នកមានជំនឿពីការសេពគប់មិត្តជំនិតដែល
មានសាសនាផ្សេងពីសាសនាឥស្លាម។

**តាហ្សៀរ**

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَتَّخِذُواْ عَدُوِّي وَعَدُوَّكُمۡ أَوۡلِيَآءَ تُلۡقُونَ إِلَيۡهِم بِٱلۡمَوَدَّةِ وَقَدۡ
كَفَرُواْ بِمَا جَآءَكُم مِّنَ ٱلۡحَقِّ يُخۡرِجُونَ ٱلرَّسُولَ وَإِيَّاكُمۡ أَن تُؤۡمِنُواْ بِٱللَّهِ رَبِّكُمۡ إِن كُنتُمۡ
خَرَجۡتُمۡ جِهَٰدٗا فِي سَبِيلِي وَٱبۡتِغَآءَ مَرۡضَاتِيۚ تُسِرُّونَ إِلَيۡهِم بِٱلۡمَوَدَّةِ وَأَنَا۠ أَعۡلَمُ بِمَآ
أَخۡفَيۡتُمۡ وَمَآ أَعۡلَنتُمۡۚ وَمَن يَفۡعَلۡهُ مِنكُمۡ فَقَدۡ ضَلَّ سَوَآءَ ٱلسَّبِيلِ ﴿١﴾ إِن يَثۡقَفُوكُمۡ يَكُونُواْ
لَكُمۡ أَعۡدَآءٗ وَيَبۡسُطُوٓاْ إِلَيۡكُمۡ أَيۡدِيَهُمۡ وَأَلۡسِنَتَهُم بِٱلسُّوٓءِ وَوَدُّواْ لَوۡ تَكۡفُرُونَ ﴿٢﴾ لَن
تَنفَعَكُمۡ أَرۡحَامُكُمۡ وَلَآ أَوۡلَٰدُكُمۡۚ يَوۡمَ ٱلۡقِيَٰمَةِ يَفۡصِلُ بَيۡنَكُمۡۚ وَٱللَّهُ بِمَا تَعۡمَلُونَ بَصِيرٞ ﴿٣﴾

1 ឱបណ្តាអ្នកដែលមានជំនឿ!ចូរពួកអ្នកប្រព្រឹត្តទង្វើរណាដែលគេបានកំណត់លើ





ពួកអ្នក។ហើយចូរពួកអ្នកកុំយកសត្រូវរបស់យើងនិងសត្រូវរបស់ពួកអ្នកធ្វើជាមិត្តសម្លាញ់។ពួកអ្នកផ្តល់ដំណឹងដោយសារទំនាក់ទំនងមិត្តភាពរវាងពួកអ្នកនឹងពួកគេ។ពួកគេមិនព្រមជឿនូវអ្វីដែលរ៉សូលុលឡោះបាននាំមកជូនពួកអ្នកគឺសាសនាឥស្លាម។ពួកគេបណ្តេញណាពីនិងពួកអ្នកចេញពីលំនៅដ្ឋានរបស់ពួកអ្នកគឺមក្កះ។ពួកគេបណ្តេញពួកអ្នកចេញដោយសារពួកអ្នកមានជំនឿចំពោះអល់ឡោះប៉ុន្តែពួកគេស្អប់ខ្ពើមចំពោះជំនឿរបស់ពួកអ្នក។បើពួកអ្នកចេញតស៊ូក្នុងផ្លូវរបស់យើងនិងស្វែងរកការសព្វព្រះទ័យរបស់យើង។ដូច្នេះពួកអ្នកពុំត្រូវយកសត្រូវរបស់យើងនិងសត្រូវរបស់ពួកអ្នកជាមិត្តសម្លាញ់ឡើយ។ពួកអ្នកលួចយកដំណឹងទៅប្រាប់ពួកគេដោយសារមូលហេតុនៃទំនាក់ទំនងមិត្តភាពនេះ។យើងដឹងនូវអ្វីដែលអ្នករាល់គ្នាកំពុងធ្វើដោយលាក់បាំងនិងបើកចំហរ។គ្មានអ្វីអាចលាក់បាំងនឹងទ្រង់បានឡើយ។ក្នុងចំណោមពួកអ្នកនរណាធ្វើអំពើបែបនេះគេបានដើរខុសផ្លូវ និងវង្វេងចេញពីផ្លូវដែលត្រឹមត្រូវ។

(2) នៅពេលដែលពួកគេជួបពួកអ្នកនិងប្រទះឃើញពួកអ្នកដោយចៃដន្យគឺពួកគេបង្ហាញភាពជាសត្រូវដែលបង្កប់ក្នុងដួងចិត្តរបស់ពួកគេចំពោះពួកអ្នក។ពួកគេលើកដៃវាយពួកអ្នកនិងអណ្តាតរបស់ពួកគេជេរប្រមាថពួកអ្នក។ល។ពួកគេប្រាថ្នាចង់ឱ្យពួកអ្នកវិលត្រឡប់ទៅរកការគ្មានជំនឿនឹងអល់ឡោះនិងរ៉សូលរបស់ទ្រង់ដូចពួកគេវិញ។

(3) នៅថ្ងៃបរលោកកូនចៅរបស់ពួកអ្នកនិងសាច់ញាតិរបស់ពួកអ្នកមិនអាចជួយជាប្រយោជន៍អ្វីដល់ពួកអ្នកទេទោះជាពួកគាហៀររួមសាមគ្គីគ្នាដើម្បីជួយអ្នកក៏ដោយ។នៅថ្ងៃបរលោកទ្រង់នឹងបំបែកពួកអ្នកចេញពីគ្នា ។ហើយអ្នកដែលត្រូវចូលឋានសួគ៌និងចូលឋានសួគ៌ហើយអ្នកដែលនឹងត្រូវចូលឋាននរកនិងចូលឋាននរក។គ្មាននរណាអាចជួយនរណាបានឡើយ។ពិតណាស់អល់ឡោះជ្រាបដឹងរាល់ទង្វើទាំងអស់។គ្មានអ្វីអាចលាក់បាំងទ្រង់បានឡើយ។ហើយគេនឹងតបស្នងទៅតាមអ្វីដែលអ្នកបានប្រព្រឹត្ត។

قَدْ كَانَتْ لَكُمْ أُسْوَةٌ حَسَنَةٌ فِيٓ إِبْرَٰهِيمَ وَٱلَّذِينَ مَعَهُۥٓ إِذْ قَالُوا۟ لِقَوْمِهِمْ إِنَّا بُرَءَٰٓؤُا۟ مِنكُمْ
وَمِمَّا تَعْبُدُونَ مِن دُونِ ٱللَّهِ كَفَرْنَا بِكُمْ وَبَدَا بَيْنَنَا وَبَيْنَكُمُ ٱلْعَدَٰوَةُ وَٱلْبَغْضَآءُ أَبَدًا حَتَّىٰ
تُؤْمِنُوا۟ بِٱللَّهِ وَحْدَهُۥٓ إِلَّا قَوْلَ إِبْرَٰهِيمَ لِأَبِيهِ لَأَسْتَغْفِرَنَّ لَكَ وَمَآ أَمْلِكُ لَكَ مِنَ ٱللَّهِ مِن
شَىْءٍ ۖ رَّبَّنَا عَلَيْكَ تَوَكَّلْنَا وَإِلَيْكَ أَنَبْنَا وَإِلَيْكَ ٱلْمَصِيرُ ٤ رَبَّنَا لَا تَجْعَلْنَا فِتْنَةً لِّلَّذِينَ كَفَرُوا۟
وَٱغْفِرْ لَنَا رَبَّنَآ ۖ إِنَّكَ أَنتَ ٱلْعَزِيزُ ٱلْحَكِيمُ ٥ لَقَدْ كَانَ لَكُمْ فِيهِمْ أُسْوَةٌ حَسَنَةٌ
لِّمَن كَانَ يَرْجُوا۟ ٱللَّهَ وَٱلْيَوْمَ ٱلْءَاخِرَ ۚ وَمَن يَتَوَلَّ فَإِنَّ ٱللَّهَ هُوَ ٱلْغَنِىُّ ٱلْحَمِيدُ ٦

(4) ជាការពិតណាស់ពួកអ្នក(អ្នកមានជំនឿ)មានអ៊ីព្រហ៊ីមជាគំរូដ៏ល្អម្នាក់និងបណ្តាអ្នកដែលរួមជំនឿជាមួយគាត់នៅពេលដែលពួកគាត់បានពោលទៅកាន់ក្រុមរបស់ពួកគាត់ថាៈពិតប្រាកដណាស់ពួកយើង មិនពាក់ព័ន្ធជាមួយពួកអ្នកនឹងអ្វីដែលពួកអ្នកកំពុងគោរពសក្ការៈផ្សេងពីអល់ឡោះឡើយ។ពួកយើងបានប្រឆាំងនឹងពួកអ្នកហើយវាបានស្តែងឱ្យឃើញថារវាងពួកយើងនិងពួកអ្នកគឺជាសត្រូវនិងស្អប់ខ្ពើមគ្នាជាដរាប។លុះត្រាតែពួកអ្នកមានជំនឿលើអល់ឡោះតែមួយគត់។ដោយមិនយកអ្វីផ្សេងមកចូលរួមជាមួយទ្រង់។ហើយពួកអ្នកមិនត្រូវពាក់ព័ន្ធជាមួយក្រុមរបស់ពួកអ្នកទៀតទេ។លើកលែងតែសំដីរបស់អ៊ីព្រហ៊ីមដែលនិយាយទៅកាន់ឪពុកគេថាខ្ញុំនឹងសុំអភ័យទោសពីព្រះជាម្ចាស់សម្រាប់លោក។ត្រង់នេះពួកអ្នកមិនត្រូវយកគំរូតាមទេ នេះគ្រាន់តែជាពាក្យសន្យារបស់គាត់ចំពោះឪពុកគាត់ប៉ុណ្ណោះ។សម្រាប់អ្នកមាន

ជំនឿមិនត្រូវសុំអភ័យទោសឱ្យពួកមុស្ហរីគីនទេ។អ្នកមិនអាចការពារពីទារុណកម្មអ
ល់ឡោះទេ។ឱម្ចាស់របស់ពួកយើង!ចំពោះទ្រង់ហើយដែលពួកយើងប្រគល់ការទុក្ខ
ចិត្ត ហើយចំពោះទ្រង់ដែលពួកយើងសារភាពទោស កំហុសហើយចំពោះទ្រង់ក៏ជា
កន្លែងវិលត្រឡប់របស់ពួកយើងដែរនៅថ្ងៃបរលោក។
5 ឱម្ចាស់របស់ពួកយើង!សូមទ្រង់មេត្តាកុំធ្វើឱ្យពួកយើងក្លាយជាការសាកល្បង
របស់ពួកដែលគ្មានជំនឿអ្វី។ឱម្ចាស់របស់ពួកយើង!សូមទ្រង់មេត្តាអភ័យទោសដល់
ពួកយើងផង។ពិតប្រាកដណាស់ទ្រង់មហាខ្លាំងពូកែមហាគតិបណ្ឌិត។
6 ជាការពិតណាស់ពួកអ្នកមានពួកគេជាគំរូដ៏ល្អសម្រាប់អ្នកណាដែលសង្ឃឹមថា
នឹងទទួលបានផលបុណ្យល្អពីអល់ឡោះនៅក្នុងលោកិយនិងថ្ងៃបរលោក។រីឯអ្នក
ណាហើយបែរចេញពីគំរូដ៏ល្អនេះពិតប្រាកដណាស់អល់ឡោះមិនត្រូវការការគោរព
តាមរបស់ពួកគេទេហើយទ្រង់មហាមានលើសលុប ជាទីកោតសរសើរបំផុត។

عَسَى ٱللَّهُ أَن يَجۡعَلَ بَيۡنَكُمۡ وَبَيۡنَ ٱلَّذِينَ عَادَيۡتُم مِّنۡهُم مَّوَدَّةٗۚ وَٱللَّهُ قَدِيرٞۚ وَٱللَّهُ غَفُورٞ رَّحِيمٞ ٧
لَّا يَنۡهَىٰكُمُ ٱللَّهُ عَنِ ٱلَّذِينَ لَمۡ يُقَٰتِلُوكُمۡ فِي ٱلدِّينِ وَلَمۡ يُخۡرِجُوكُم مِّن دِيَٰرِكُمۡ أَن تَبَرُّوهُمۡ وَتُقۡسِطُوٓاْ
إِلَيۡهِمۡۚ إِنَّ ٱللَّهَ يُحِبُّ ٱلۡمُقۡسِطِينَ ٨ إِنَّمَا يَنۡهَىٰكُمُ ٱللَّهُ عَنِ ٱلَّذِينَ قَٰتَلُوكُمۡ فِي ٱلدِّينِ وَأَخۡرَجُوكُم
مِّن دِيَٰرِكُمۡ وَظَٰهَرُواْ عَلَىٰٓ إِخۡرَاجِكُمۡ أَن تَوَلَّوۡهُمۡۚ وَمَن يَتَوَلَّهُمۡ فَأُوْلَٰٓئِكَ هُمُ ٱلظَّٰلِمُونَ ٩

7 សង្ឃឹមថាអល់ឡោះនឹងធ្វើឱ្យមានសេចក្តីស្រលាញ់រវាងពួកអ្នកនិងពួកសត្រូវ
របស់ពួកអ្នកពួកមុស្ហរីគីននៅម៉ាក្កះ។ដោយអល់ឡោះបានចង្អុលបង្ហាញពួកគេឱ្យ
បានចូលសាសនាឥស្លាមហើយពួកគេនឹងក្លាយជាបងប្អូនជាមួយពួកអ្នកក្នុង
សាសនាដូចគ្នា។អល់ឡោះទ្រង់ជាព្រះដ៏មានអនុភាពអាចធ្វើឱ្យចិត្តរបស់ពួកគេប្រែ
ក្លាយជាមានជំនឿ។ពិតប្រាកដណាស់ទ្រង់មហាអភ័យទោសដល់អ្នកដែលសារភាព
កំហុសនិងមហាមេត្តាករុណាដល់ពួកគេ។
8 ទ្រង់មិនហាមឃាត់ពួកអ្នកពីការធ្វើល្អជាមួយពួកកាហ្វៀរដែលមិនធ្វើសង្គ្រាម
ជាមួយនឹងពួកអ្នកដោយសារពួកអ្នកបានចូលឥស្លាមហើយមិនបណ្តេញពួកអ្នក
ចេញពីភូមិស្រុករបស់អ្នកឡើយ។ចូរពួកអ្នកផ្តល់ភាពយុត្តិធម៌ដល់ពួកគេនឹងការ
គោរពសិទ្ធិរបស់ពួកគេ។ដូចអ្វីដែលអាស្មាអ៍ ពិនតី អាពូពេកើរបានធ្វើចំពោះម្តាយ
របស់គាត់ដែលគ្មានជំនឿបន្ទាប់ពីនាងបានសុំអនុញ្ញាតពីណាពី។ហើយគាត់បាន
អនុញ្ញាតឱ្យប្រស្រ័យទាក់ទងគ្នា។ពិតណាស់អល់ឡោះទ្រង់ស្រលាញ់សព្វព្រះទ័យ
ចំពោះពួកអ្នកដែលប្រកាន់នូវភាពយុត្តិធម៌ដែលបានផ្តល់ភាពយុត្តិធម៌ដល់ខ្លួនរបស់
គេនិងក្រុមគ្រួសាររបស់គេ។
9 តាមពិតអល់ឡោះទ្រង់ហាមឃាត់អំពីពួកកាហ្វៀរដែលធ្វើសង្គ្រាមជាមួយនឹង
ពួកអ្នកក្រោយពីពួកអ្នកមានជំនឿ។ហើយបណ្តេញពួកអ្នកចេញពីភូមិស្រុក។និងអ្នក
ដែលបានគាំទ្រក្នុងការបណ្តេញនោះ។ពួកអ្នកពុំត្រូវសេពគប់ពួកគេជាមិត្តសម្លាញ់
ឡើយ។អ្នកណាដែលបានសេពគប់ពួកគេជាមិត្តសម្លាញ់ពិតណាស់គេជាអ្នកដែល
ប្រព្រឹត្តអំពើអយុត្តិធម៌លើខ្លួនរបស់ពួកគេដោយទទួលយកភាពមហន្តរាយនឹងមូល
ហេតុប្រឆាំងនឹងបទបញ្ញត្តិរបស់អល់ឡោះ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا جَآءَكُمُ ٱلۡمُؤۡمِنَٰتُ مُهَٰجِرَٰتٖ فَٱمۡتَحِنُوهُنَّۖ ٱللَّهُ أَعۡلَمُ بِإِيمَٰنِهِنَّۖ فَإِنۡ
عَلِمۡتُمُوهُنَّ مُؤۡمِنَٰتٖ فَلَا تَرۡجِعُوهُنَّ إِلَى ٱلۡكُفَّارِۖ لَا هُنَّ حِلّٞ لَّهُمۡ وَلَا هُمۡ يَحِلُّونَ لَهُنَّۖ وَءَاتُوهُم





مَآ أَنفَقُواْۚ وَلَا جُنَاحَ عَلَيۡكُمۡ أَن تَنكِحُوهُنَّ إِذَآ ءَاتَيۡتُمُوهُنَّ أُجُورَهُنَّۚ وَلَا تُمۡسِكُواْ بِعِصَمِ
ٱلۡكَوَافِرِ وَسۡـَٔلُواْ مَآ أَنفَقۡتُمۡ وَلۡيَسۡـَٔلُواْ مَآ أَنفَقُواْۚ ذَٰلِكُمۡ حُكۡمُ ٱللَّهِ يَحۡكُمُ بَيۡنَكُمۡۖ وَٱللَّهُ عَلِيمٌ
حَكِيمٞ ١٠ وَإِن فَاتَكُمۡ شَيۡءٞ مِّنۡ أَزۡوَٰجِكُمۡ إِلَى ٱلۡكُفَّارِ فَعَاقَبۡتُمۡ فَـَٔاتُواْ ٱلَّذِينَ ذَهَبَتۡ
أَزۡوَٰجُهُم مِّثۡلَ مَآ أَنفَقُواْۚ وَٱتَّقُواْ ٱللَّهَ ٱلَّذِيٓ أَنتُم بِهِۦ مُؤۡمِنُونَ ١١

10 ឱបណ្តាអ្នកដែលមានជំនឿ!នៅពេលដែលក្រុមស្ត្រីអន្តោប្រវេសន៍ដែលមានជំនឿ
បានធ្វើដំណើរចេញពីទឹកដីការហ្វៀរមកកាន់ទឹកដីឥស្លាមចូរពួកអ្នកសាកល្បងពួកនាង
ពីជំនឿរបស់ពួកនាងចុះ។ អល់ឡោះដឹងនូវជំនឿរបស់ពួកនាង។គ្មានអ្វីម្យ៉ាងអាចលាក់
បាំងទ្រង់បានឡើយ។បើសិនជាពួកដឹងថាពួកនាងជាអ្នកមានជំនឿតាមភាពជាក់ស្តែង
បន្ទាប់ពីការសាកល្បងដែលគេបង្គាប់ប្រើពួកអ្នក។ចូរកុំបញ្ជូនពួកនាងទៅឱ្យប្តីៗរបស់
ពួកនាងដែលជាកាហ្វៀរ។ពួកនាងមិនហាឡាល់សម្រាប់ពួកគេ ហើយពួកគេមិនហាឡា
ល់សម្រាប់ពួកនាង។ស្ត្រីមានជំនឿមិនហាឡាល់សម្រាប់កាហ្វៀរទេ។ចូរផ្តល់សំណង
ដល់ប្តីរបស់ស្ត្រីដែលបានចូលឥស្លាមចំពោះរាល់ការចំណាយប្តីរបស់នាងសម្រាប់នាង
ដូចជាថ្លៃខាន់ស្លា។ពុំមានបាបកម្មទេដែលពួកអ្នករៀបការជាមួយនឹងពួកនាង។បន្ទាប់ពី
នាងអស់អ៊ិតហ្ទះហើយពួកអ្នកផ្តល់ថ្លៃខាន់ស្លាឱ្យពួកនាង។អ្នកដែលមានប្រពន្ធជាស្ត្រី
កាហ្វៀរឬត្រឡប់ចេញពីឥស្លាមគឺនាងពុំមែនជាប្រពន្ធរបស់គេទេ។ពីព្រោះចំណង
អាពាហ៍ពិពាហ៍ត្រូវកាត់ផ្តាច់ដោយសារសាសនាខុសគ្នា។ចូរពួកអ្នកយកមកវិញដែរនូវ
ខាន់ស្លាពីប្រពន្ធរបស់ពួកអ្នកដែលបោះបង់សាសនាឥស្លាម។ហើយពួកគេក៏ត្រូវសុំយក
មកវិញដែរនូវខាន់ស្លាពីប្រពន្ធរបស់ពួកគេដែលបានចូលឥស្លាម។ទាំងនោះគឺជាច្បាប់របស់
អល់ឡោះដែលទ្រង់កាត់សេចក្តីរវាងពួកអ្នកក្នុងការសងខាន់ស្លាឱ្យគ្នាទៅវិញទៅមក។
ហើយទ្រង់កាត់ក្តីទៅតាមអ្វីដែលទ្រង់មានចេតនា។ហើយអល់ឡោះមហាដឹងពីស្ថាន
ភាពរបស់មនុស្សលោក។ហើយមហាគតិបណ្ឌិតលើការដាក់ច្បាប់លើមនុស្សលោក។
11 បើសិនជាភរិយារបស់ពួកអ្នកបោះបង់សាសនាត្រលប់ទៅរកកាហ្វៀរហើយពួក
អ្នកសុំយកមកវិញនូវខាន់ស្លាតែត្រូវគេបដិសេធមិនផ្តល់ឱ្យពួកអ្នកវិញនោះក្រោយពី
ពួកអ្នកបានច្បាំងឈ្នះនិងទទួល បានជ័យភណ្ឌពីពួកគ្មានជំនឿនោះគឺពួកអ្នកត្រូវតែ
ផ្តល់នូវជ័យភណ្ឌនោះឱ្យបណ្តាអ្នកដែលភរិយារបស់ពួកគេវិលទៅរកភាពគ្មានជំនឿ
វិញស្មើនឹងអ្វីដែលពួកគេបានចំណាយ។ហើយចូរពួកអ្នកកោតខ្លាចអល់ឡោះក្នុង
នាមពួកអ្នកជាអ្នកដែលមានជំនឿលើទ្រង់ដោយអនុវត្តតាមអ្វីដែលទ្រង់បញ្ជានិង
ជៀសឱ្យឆ្ងាយពីអ្វីដែលទ្រង់ហាមឃាត់។

يَٰٓأَيُّهَا ٱلنَّبِيُّ إِذَا جَآءَكَ ٱلۡمُؤۡمِنَٰتُ يُبَايِعۡنَكَ عَلَىٰٓ أَن لَّا يُشۡرِكۡنَ بِٱللَّهِ شَيۡـٔٗا وَلَا يَسۡرِقۡنَ وَلَا
يَزۡنِينَ وَلَا يَقۡتُلۡنَ أَوۡلَٰدَهُنَّ وَلَا يَأۡتِينَ بِبُهۡتَٰنٖ يَفۡتَرِينَهُۥ بَيۡنَ أَيۡدِيهِنَّ وَأَرۡجُلِهِنَّ وَلَا
يَعۡصِينَكَ فِي مَعۡرُوفٖ فَبَايِعۡهُنَّ وَٱسۡتَغۡفِرۡ لَهُنَّ ٱللَّهَۚ إِنَّ ٱللَّهَ غَفُورٞ رَّحِيمٞ ١٢

12 ឱណាពី(មូហាំម៉ាត់)!ប្រសិនបើបណ្តាស្ត្រីដែលមានជំនឿធ្វើដំណើរមកកាន់អ្នក
ដោយពួកនាងបានប្តេជ្ញាចិត្ត(ដូចអ្វីដែលបានកើតឡើងពេលបើកម៉ាក្កះ)ជាមួយអ្នក
ថាពួកនាងនឹងមិនធ្វើស្ទីរិកនឹងអល់ឡោះឡើយហើយពួកនាងមិនលួចនិងមិនធ្វើហ្ស៊ី
ណានិងមិនសម្លាប់កូនចៅរបស់ពួកនាងដូចជាទង្វើរបស់ស្ត្រីទាំងឡាយនៅសម័យ
ចាហីលីយ៉ះគឺសម្លាប់កូនស្រីទាំងរស់។ហើយមិនក្លែងបន្លំកូនអ្នកដទៃថាកូនប្តីរបស់ខ្លួ
ន។ព្រមទាំងពួកនាងមិនប្រព្រឹត្តល្មើសនឹងអ្នកចំពោះគ្រប់កិច្ចការទាំងឡាយដែលជា



ការប្រតិបត្តិចំពោះអល់ឡោះ។ដូចជាការហាមឃាត់មិនឲ្យរៀបរាប់ហែកសម្លៀកបំពាក់ប៉ោចសក់និងហែកហោប៉ៅ។ចូរអ្នកទទួលយកនូវការ ប្ដេជ្ញាចិត្តរបស់ពួកនាងចុះ។ ហើយចូរអ្នកសុំពីអល់ឡោះឱ្យអភ័យទោសដល់ពួកនាង។ពិតប្រាកដណាស់អល់ឡោះមហាអភ័យទោសសម្រាប់អ្នកដែលទទួលសារភាពកំហុសនិងមហាអាណិតស្រឡាញ់ដល់ពួកគេ។

**ស៊ូរ៉ោះនេះបានចាប់ផ្ដើមដោយការព្រមានលើការសេពគប់មិត្តសម្លាញ់ដែលជាសត្រូវរបស់អល់ឡោះហើយក៏បញ្ចប់ទៅវិញដោយការព្រមានបន្ថែមលើអ្វីដែលបានរៀបរាប់ពីមុន។អល់ឡោះបានមានបន្ទូលថា៖**

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تَتَوَلَّوۡاْ قَوۡمًا غَضِبَ ٱللَّهُ عَلَيۡهِمۡ قَدۡ يَئِسُواْ مِنَ ٱلۡأٓخِرَةِ كَمَا يَئِسَ ٱلۡكُفَّارُ مِنۡ أَصۡحَٰبِ ٱلۡقُبُورِ ١٣

(13) ឱបណ្ដាអ្នកដែលមានជំនឿ!ចូរប្រព្រឹត្តនូវអ្វីដែលគេបានកំណត់លើពួកអ្នក។ចូរពួកអ្នកកុំយកក្រុមដែលអល់ឡោះខឹងសម្បាចំពោះពួកគេធ្វើជាមិត្តភក្ដិឱ្យសោះ។ជាការពិតណាស់ពួកគេអស់សង្ឃឹមចំពោះផលបុណ្យរបស់អល់ឡោះនៅថ្ងៃបរលោកដូចជាពួកដែលគ្មានជំនឿអស់សង្ឃឹមចំពោះបណ្ដា អ្នកដែលនៅក្នុងផ្នូរថាពួកគេមិនត្រូវបានអល់ឡោះធ្វើឱ្យរស់ ឡើងវិញឡើយ។

## អាស់សហ្វ

**គោលបំណងនៃស៊ូរ៉ោះ**លើកទឹកចិត្តដល់អ្នកមានជំនឿឱ្យជួយគាំទ្រសាសនាឥស្លាមនិងធ្វើសង្គ្រាមក្នុងផ្លូវអល់ឡោះ។

**តាហ្វសៀរ**

سَبَّحَ لِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۖ وَهُوَ ٱلۡعَزِيزُ ٱلۡحَكِيمُ ١ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لِمَ تَقُولُونَ مَا لَا تَفۡعَلُونَ ٢ كَبُرَ مَقۡتًا عِندَ ٱللَّهِ أَن تَقُولُواْ مَا لَا تَفۡعَلُونَ ٣ إِنَّ ٱللَّهَ يُحِبُّ ٱلَّذِينَ يُقَٰتِلُونَ فِي سَبِيلِهِۦ صَفّٗا كَأَنَّهُم بُنۡيَٰنٞ مَّرۡصُوصٞ ٤

(1) អ្វីៗនៅលើមេឃជាច្រើនជាន់និងអ្វីៗនៅលើផែនដីបានលើកតម្កើងអល់ឡោះ។ ហើយទ្រង់មហាខ្លាំងពូកែគ្មានអ្វីអាចប្រជែងនឹងទ្រង់បានឡើយនិងមហាគតិបណ្ឌិត។

(2) ឱបណ្ដាអ្នកដែលមានជំនឿ!ហេតុអ្វីបានជាពួកអ្នកនិយាយថាពួកយើងបានធ្វើអ្វីម្យ៉ាងតែតាមពិតពួកអ្នកមិនបានធ្វើ?ដូចម្នាក់បាននិយាយថា៖ខ្ញុំបានសម្លាប់គេនឹងដាវរបស់ខ្ញុំហើយខ្ញុំបានវាយគេតែគេមិនបានសម្លាប់នឹងដាវរបស់គេទេហើយក៏មិនបានវាយគេដែរ។

(3) ពិតណាស់អល់ឡោះស្អប់ខ្ពើមបំផុតនូវអ្វីដែលពួកអ្នកនិយាយហើយពួកអ្នកមិនបានធ្វើ។វាមិនាកសម្បទេសម្រាប់អ្នកមានជំនឿដែលធ្វើបែបនេះគេគប្បីស្មោះត្រង់ចំពោះអល់ឡោះហើយបញ្ជាក់ភាពស្មោះត្រង់ដោយទង្វើនិងសម្ដីរបស់គេ។

(4) ពិតណាស់អល់ឡោះទ្រង់សព្វព្រះទ័យពួកអ្នកដែលច្បាំងតស៊ូក្នុងផ្លូវរបស់ទ្រង់។ ពួកគេតំរៀបគ្នាជាជួរ។ពួកគេចងបាច់គ្នាជាផ្លុងមួយប្រៀបដូចជាសំណង់អគាររឹងមាំ។ជាប់គ្នាក្លាយជាផ្ទៃតែមួយ។

**អល់ឡោះបានរំលឹកពីការធ្វើសង្គ្រាមនឹងបានសរសើរចំពោះអ្នកមានជំនឿលើការរួបរួមគ្នាលើការច្បាំងតស៊ូក្នុងផ្លូវរបស់ទ្រង់។ទ្រង់ក៏បានរំលឹកពីក្រុមណាពីម៉ូសានិងក្រុមណាពីអ៊ីសាដែលបានប្រឆាំងនឹងគាត់ទាំងពីរ។ជាការព្រមានដល់អ៊ុម៉ាត់មូហាំម៉ាត់កុំឱ្យបំពានលើណាពី។អល់ឡោះបានមានបន្ទូលថា៖**

وَإِذْ قَالَ مُوسَىٰ لِقَوْمِهِۦ يَٰقَوْمِ لِمَ تُؤْذُونَنِى وَقَد تَّعْلَمُونَ أَنِّى رَسُولُ ٱللَّهِ
إِلَيْكُمْ ۖ فَلَمَّا زَاغُوٓا۟ أَزَاغَ ٱللَّهُ قُلُوبَهُمْ ۚ وَٱللَّهُ لَا يَهْدِى ٱلْقَوْمَ ٱلْفَٰسِقِينَ ٥
وَإِذْ قَالَ عِيسَى ٱبْنُ مَرْيَمَ يَٰبَنِىٓ إِسْرَٰٓءِيلَ إِنِّى رَسُولُ ٱللَّهِ إِلَيْكُم مُّصَدِّقًا لِّمَا بَيْنَ يَدَىَّ مِنَ ٱلتَّوْرَىٰةِ
وَمُبَشِّرًۢا بِرَسُولٍ يَأْتِى مِنۢ بَعْدِى ٱسْمُهُۥٓ أَحْمَدُ ۖ فَلَمَّا جَآءَهُم بِٱلْبَيِّنَٰتِ قَالُوا۟ هَٰذَا سِحْرٌ مُّبِينٌ ٦
5 ចូររំឭកចុះខណៈដែលមូសាបាននិយាយទៅកាន់ក្រុមរបស់គាត់ថា ឱក្រុមរបស់
ខ្ញុំ! ហេតុអ្វីបានជាពួកអ្នកធ្វើបាបខ្ញុំដោយប្រឆាំងនឹងបញ្ជារបស់ខ្ញុំខណៈដែលពួក
អ្នកដឹងច្បាស់ថាខ្ញុំពិតជាអ្នកនាំសាររបស់អល់ឡោះមកកាន់ពួកអ្នកនោះ? ហើយនៅ
ពេលដែលពួកគេគេចចេញពីមាគ៌ាត្រឹមត្រូវទ្រង់ក៏បានធ្វើឱ្យចិត្តរបស់ពួកគេកាន់តែ
ឃ្លាតឆ្ងាយពីមាគ៌ាត្រឹមត្រូវទៅទៀត។ ហើយអល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុម
ដែលល្មើសនឹងបទបញ្ជារបស់ទ្រង់ឡើយ។
6 ចូររំឭកចុះខណៈអ៊ីសាកូនម៉ារយ៉ាំបានពោលថាៈ ឱអំបូរអ៊ីស្រាអែល! ពិតប្រាកដ
ណាស់ខ្ញុំជាអ្នកនាំសាររបស់អល់ឡោះមកកាន់ពួកអ្នកដោយបញ្ជាក់អំពីអ្វីៗដែលមាន
មុនខ្ញុំនៅក្នុងគម្ពីរតាវរ៉ត ហើយខ្ញុំពុំបាននាំមកនូវអ្វីដែលផ្ទុយនឹងគម្ពីរតាវរ៉តនោះដែរ។
និងផ្តល់ដំណឹងរីករាយដល់ពួកអ្នកអំពីអ្នកនាំសារម្នាក់ដែលនឹងមកដល់បន្ទាប់ពីខ្ញុំ
ដែលគេមានឈ្មោះថាអះម៉ាត់ (មូហាំម៉ាត់)។ ប៉ុន្តែនៅពេលដែលគាត់បានមកដល់ពួក
គេជាមួយនឹងភស្តុតាងដ៏ច្បាស់លាស់ជាច្រើននោះ ពួកគេបែរជានិយាយថាៈ នេះជាម
ន្តអាគមយ៉ាងច្បាស់លាស់។ ពួកយើងមិនតាមឡើយ។

وَمَنْ أَظْلَمُ مِمَّنِ ٱفْتَرَىٰ عَلَى ٱللَّهِ ٱلْكَذِبَ وَهُوَ يُدْعَىٰٓ إِلَى ٱلْإِسْلَٰمِ ۚ وَٱللَّهُ لَا يَهْدِى ٱلْقَوْمَ ٱلظَّٰلِمِينَ
٧ يُرِيدُونَ لِيُطْفِـُٔوا۟ نُورَ ٱللَّهِ بِأَفْوَٰهِهِمْ وَٱللَّهُ مُتِمُّ نُورِهِۦ وَلَوْ كَرِهَ ٱلْكَٰفِرُونَ ٨
هُوَ ٱلَّذِىٓ أَرْسَلَ رَسُولَهُۥ بِٱلْهُدَىٰ وَدِينِ ٱلْحَقِّ لِيُظْهِرَهُۥ عَلَى ٱلدِّينِ كُلِّهِۦ وَلَوْ كَرِهَ ٱلْمُشْرِكُونَ ٩
7 តើមានអ្នកណាដែលបំពានជាងអ្នកដែលប្រឌិតពាក្យភូតកុហកលើអល់ឡោះ
ដោយចាត់ទុកគេជាព្រះគោរពសក្ការៈផ្សេងពីអល់ឡោះខណៈដែលគេអំពាវនាវឱ្យទៅ
កាន់សាសនាអ៊ីស្លាមជាសាសនាជឿស្មោះសរចំពោះអល់ឡោះតែមួយគត់នោះ? ហើយ
អល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលបំពានដោយធ្វើស្ហ៊ីរិកនិងបាបកម្មឡើយ។
8 ពួកប្រឌិតពាក្យភូតកុហកចង់ពន្លត់នូវពន្លឺរបស់អល់ឡោះ (សាសនាអ៊ីស្លាម)
ដោយសំដីបោកប្រាស់របស់ពួកគេ។ អល់ឡោះទ្រង់បំពេញពន្លឺរបស់ទ្រង់ ដោយ
បំផុសសាសនាឥស្លាមឱ្យលេចឡើងខ្ពស់ត្រដែតមិនថានៅទិសខាងកើតឬខាងលិច
ឡើយ ហើយឈ្នះអស់សាសនាទាំងឡាយ។
9 ទ្រង់ជាអ្នកដែលបានបញ្ជូនរ៉សូលុលឡោះរបស់ទ្រង់មូហាំម៉ាត់នាំមកជាមួយនូវ
សាសនាឥស្លាមជាសាសនាចង្អុលបង្ហាញនិងនាំទៅរកផ្លូវល្អជាសាសនាមានចំណេះ
ដឹងដែលមានប្រយោជន៍និងទង្វើកុសលដើម្បីធ្វើឱ្យសាសនាខ្ពស់ត្រដែត ហើយឈ្នះ
អស់សាសនាទាំងឡាយ។ បើទោះជាពួកមុស្ហរីគីនមានចិត្តស្អប់ខ្ពើមយ៉ាងណាក៏ដោ
យ។ គ្មានឧបសគ្គអ្វីរាំងសាសនានេះបានឡើយ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ هَلْ أَدُلُّكُمْ عَلَىٰ تِجَٰرَةٍ تُنجِيكُم مِّنْ عَذَابٍ أَلِيمٍ ١٠ تُؤْمِنُونَ بِٱللَّهِ وَرَسُولِهِۦ
وَتُجَٰهِدُونَ فِى سَبِيلِ ٱللَّهِ بِأَمْوَٰلِكُمْ وَأَنفُسِكُمْ ۚ ذَٰلِكُمْ خَيْرٌ لَّكُمْ إِن كُنتُمْ تَعْلَمُونَ ١١ يَغْفِرْ لَكُمْ
ذُنُوبَكُمْ وَيُدْخِلْكُمْ جَنَّٰتٍ تَجْرِى مِن تَحْتِهَا ٱلْأَنْهَٰرُ وَمَسَٰكِنَ طَيِّبَةً فِى جَنَّٰتِ عَدْنٍ ۚ ذَٰلِكَ ٱلْفَوْزُ





ٱلْعَظِيمُ ﴿١٢﴾ وَأُخْرَىٰ تُحِبُّونَهَا ۖ نَصْرٌ مِّنَ ٱللَّهِ وَفَتْحٌ قَرِيبٌ ۗ وَبَشِّرِ ٱلْمُؤْمِنِينَ ﴿١٣﴾

10 ឱបណ្ដាអ្នកដែលមានជំនឿ!ចូរប្រព្រឹត្តនូវអ្វីដែលគេបានកំណត់លើពួកអ្នក។តើចង់ឱ្យយើងបង្ហាញប្រាប់ពួកអ្នកអំពីការជួញដូរមួយដែលសង្គ្រោះពួកអ្នកឱ្យរួចផុតពីទារុណកម្មដ៏ឈឺចាប់ដែរឬទេ។

11 ជំនួញនោះគឺពួកអ្នកត្រូវមានជំនឿលើអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់។ហើយនិងតស៊ូក្នុងមាគ៌ារបស់អល់ឡោះដោយទ្រព្យសម្បត្តិនិងខ្លួនប្រាណរបស់ពួកអ្នកផ្ទាល់ប្រាថ្នាចង់បានការព្រមលួមពីអល់ឡោះ។ទង្វើដែលបានរៀបរាប់ទាំងនោះគឺជាការប្រសើរបំផុតសម្រាប់ពួកអ្នកប្រសិនបើពួកអ្នកដឹងនិងព្យាយាមអនុវត្តវា។

12 ផលជំនេញពីជំនួញនេះគឺអល់ឡោះនឹងអភ័យទោសដល់ពួកអ្នកចំពោះបាបកម្មទាំងឡាយរបស់ពួកអ្នក។ហើយទ្រង់នឹងបញ្ចូលពួកអ្នកទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវា។ព្រមទាំងមានកន្លែងជាទីមនោរម្យនៅក្នុងឋានសួគ៌។ដោយគ្មានការផ្លាស់ប្ដូរចេញឡើយ។រង្វាន់ដែលបានរៀបរាប់នោះគឺជាជោគជ័យមួយដ៏ធំធេងគ្មានអ្វីប្រៀបផ្ទឹមឡើយ។

13 អំពីការចំនេញក្នុងជំនួញនេះដែរដែលជាប្រាថ្នាផ្សេងទៀតដែលពួកអ្នកពេញចិត្តចង់បានវានៅក្នុងលោកិយនេះគឺគឺការគាំទ្រនិងជំនួយរបស់អល់ឡោះសម្រាប់ពួកអ្នកនិងជ័យជំនះដ៏ឆាប់ខាងមុខគឺការរំដោះម៉ាក្កះនិងកន្លែងផ្សេងទៀត។ហើយចូរអ្នក(មូហាំម៉ាត់)ផ្ដល់ដំណឹងរីករាយដល់បណ្ដាអ្នកដែលមានជំនឿចុះនូវដំណឹងជ័យជំនះនិងការរំដោះទឹកដីនៅក្នុងលោកិយនិងដំណឹងឋានសួគ៌នៅថ្ងៃបរលោក។

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ كُونُوٓا۟ أَنصَارَ ٱللَّهِ كَمَا قَالَ عِيسَى ٱبْنُ مَرْيَمَ لِلْحَوَارِيِّـۧنَ مَنْ أَنصَارِىٓ إِلَى ٱللَّهِ ۖ قَالَ ٱلْحَوَارِيُّونَ نَحْنُ أَنصَارُ ٱللَّهِ ۖ فَـَٔامَنَت طَّآئِفَةٌ مِّنۢ بَنِىٓ إِسْرَٰٓءِيلَ وَكَفَرَت طَّآئِفَةٌ ۖ فَأَيَّدْنَا ٱلَّذِينَ ءَامَنُوا۟ عَلَىٰ عَدُوِّهِمْ فَأَصْبَحُوا۟ ظَـٰهِرِينَ ﴿١٤﴾

14 ឱបណ្ដាអ្នកដែលមានជំនឿ!ចូរប្រព្រឹត្តនូវអ្វីដែលគេបានកំណត់លើពួកអ្នក។ចូរពួកអ្នកលើកស្ទួយសាសនាអល់ឡោះដែលរ៉ស៊ូលុលឡោះបាននាំមកដូចជាការជួយរបស់ហាវ៉ារីយីន(ក្រុមណាពីអ៊ីសា)ខណៈដែលអ៊ីសាកូនម៉ារយ៉ាំបានពោលទៅកាន់ពួកគេថាតើអ្នកណាខ្លះចូលរួមជាមួយខ្ញុំដើម្បីលើកស្ទួយសាសនាអល់ឡោះនោះ?ពួកគេបានឆ្លើយថាពួកយើងគឺជាអ្នកចូលរួមលើកស្ទួយសាសនាអល់ឡោះ។មួយក្រុមនៃកូនចៅអ៊ីស្រាអែលបានជឿចំពោះណាពីអ៊ីសា។ហើយមួយក្រុមផ្សេងទៀតបានប្រឆាំងមិនព្រមជឿ។ហើយយើងបានជួយបណ្ដាអ្នកដែលមានជំនឿឱ្យមានកម្លាំងខ្លាំងក្លាជាងពួកសត្រូវរបស់ពួកគេហើយពួកគេក៏បានក្លាយជាអ្នកដែលទទួលបានជ័យជំនះ។

## អាល់ជូមូអះ

**គោលបំណងនៃស៊ូរ៉ោះ:** បញ្ជាក់ពីការប្រោះប្រទានពីអល់ឡោះដល់អ៊ុម៉ាត់នេះដោយការលើកតម្កើងនិងចង្អុលបង្ហាញពីរ៉ស៊ូលុលឡោះបន្ទាប់ពីវង្វេង។ហើយប្រកាន់ខ្ជាប់នឹងការប្រតិបត្តតាម។ហើយព្រមានពីការប្រដូចនឹងពួកយ៉ាហ៊ូទ។

**តាហ្សៀរ**

يُسَبِّحُ لِلَّهِ مَا فِى ٱلسَّمَـٰوَٰتِ وَمَا فِى ٱلْأَرْضِ ٱلْمَلِكِ ٱلْقُدُّوسِ ٱلْعَزِيزِ ٱلْحَكِيمِ ﴿١﴾ هُوَ ٱلَّذِى بَعَثَ فِى ٱلْأُمِّيِّـۧنَ رَسُولًا مِّنْهُمْ يَتْلُوا۟ عَلَيْهِمْ ءَايَـٰتِهِۦ وَيُزَكِّيهِمْ وَيُعَلِّمُهُمُ ٱلْكِتَـٰبَ وَٱلْحِكْمَةَ وَإِن كَانُوا۟ مِن قَبْلُ لَفِى ضَلَـٰلٍ مُّبِينٍ ﴿٢﴾ وَءَاخَرِينَ مِنْهُمْ لَمَّا يَلْحَقُوا۟ بِهِمْ ۚ وَهُوَ ٱلْعَزِيزُ





ٱلْحَكِيمُ ﴿٣﴾ ذَٰلِكَ فَضْلُ ٱللَّهِ يُؤْتِيهِ مَن يَشَآءُ ۚ وَٱللَّهُ ذُو ٱلْفَضْلِ ٱلْعَظِيمِ ﴿٤﴾

1 អ្វីៗដែលនៅលើមេឃជាច្រើនជាន់និងអ្វីៗដែលនៅលើផែនដីលើកតម្កើងអល់ឡោះ ដែលជ្រះស្អាតពីរាល់កង្វះខាតទាំងឡាយ។ទ្រង់ជាស្តេចតែមួយគត់ដ៏មហាជ្រះស្អាតពីរាល់កង្វះខាតទាំងឡាយ។មហាខ្លាំងពូកែគ្មានអ្វីអាចប្រៀបបាននិងមហា គតិបណ្ឌិត។

2 ទ្រង់គឺជាអ្នកដែលបានចាត់តាំងអ្នកអរ៉ាប់ម្នាក់ដែលមិនចេះអាននិងមិនចេះសរសេរធ្វើជាអ្នកនាំសារដែលចេញពីមកពីស្មាសន៍របស់ពួកគេ។ដោយឱ្យគាត់សូត្រអាយ៉ាត់ៗរបស់ទ្រង់ដែលបានបញ្ចុះលើគាត់ដើម្បីលាងសម្អាតពួកគេពីភាពគ្មានជំនឿនិងទង្វើអសីលធម៌។ព្រមទាំងបង្រៀនគម្ពីរគួរអាននិងស៊ុណ្ណះដល់ពួកគេ។ខណៈដែលពួកគេកាលពីមុនស្ថិតនៅក្នុងភាពវង្វេងយ៉ាងច្បាស់លាស់នោះដោយពួកគេគោរពរូបបដិមាបង្គួរឈាមគ្នានិងផ្តាច់ទំនាក់ទំនងសាច់ញាតិ។

3 ហើយទ្រង់ក៏បានបញ្ជូនអ្នកនាំសារទៅកាន់ក្រុមផ្សេងទៀតក្នុងចំណោមពួកគេដែលពួកទាំងនោះមិនទាន់បានជួបពួកគេ( ពួកមូស្លីម )ឡើយ។ហើយទ្រង់មហាខ្លាំងពូកែគ្មានអ្វីអាចប្រៀបបាននិងមហាគតិបណ្ឌិត។

4 អ្វីៗដែលបានរៀបរាប់ទាំងនោះ( ការចាត់តាំងអ្នកនាំសារ )គឺជាការប្រោសប្រទានរបស់អល់ឡោះ ដែលទ្រង់ប្រទានឱ្យអ្នកណាដែលទ្រង់មានចេតនា។ហើយអល់ឡោះមានការប្រោសប្រទានដ៏ធំធេង។ហើយក្នុងចំណោមការប្រោសប្រទាននោះដែរគឺការចាត់តាំងអ្នកនាំសារទៅដល់មនុស្សលោកទាំងអស់។

**បន្ទាប់ពីអល់ឡោះបានរៀបរាប់ពីការប្រោសប្រទានដោយការចាត់តាំងអ្នកនាំសារនិងបញ្ចុះគម្ពីគួរអានហើយទ្រង់បានរំលឹកពីការប្រឆាំងរបស់ក្រុមណាពីមូសាលើតៅរ៉តជាការព្រមានដល់អ៊ូម៉ាត់នេះកុំឱ្យយកគំរូតាម។អល់ឡោះបានមានប្រសាសន៍ថា៖**

مَثَلُ ٱلَّذِينَ حُمِّلُوا۟ ٱلتَّوْرَىٰةَ ثُمَّ لَمْ يَحْمِلُوهَا كَمَثَلِ ٱلْحِمَارِ يَحْمِلُ أَسْفَارًۢا ۚ بِئْسَ
مَثَلُ ٱلْقَوْمِ ٱلَّذِينَ كَذَّبُوا۟ بِـَٔايَٰتِ ٱللَّهِ ۚ وَٱللَّهُ لَا يَهْدِى ٱلْقَوْمَ ٱلظَّٰلِمِينَ ﴿٥﴾
قُلْ يَٰٓأَيُّهَا ٱلَّذِينَ هَادُوٓا۟ إِن زَعَمْتُمْ أَنَّكُمْ أَوْلِيَآءُ لِلَّهِ مِن دُونِ ٱلنَّاسِ فَتَمَنَّوُا۟ ٱلْمَوْتَ
إِن كُنتُمْ صَٰدِقِينَ ﴿٦﴾ وَلَا يَتَمَنَّوْنَهُۥٓ أَبَدًۢا بِمَا قَدَّمَتْ أَيْدِيهِمْ ۚ وَٱللَّهُ عَلِيمٌۢ بِٱلظَّٰلِمِينَ
﴿٧﴾ قُلْ إِنَّ ٱلْمَوْتَ ٱلَّذِى تَفِرُّونَ مِنْهُ فَإِنَّهُۥ مُلَٰقِيكُمْ ۖ ثُمَّ تُرَدُّونَ إِلَىٰ عَٰلِمِ ٱلْغَيْبِ
وَٱلشَّهَٰدَةِ فَيُنَبِّئُكُم بِمَا كُنتُمْ تَعْمَلُونَ ﴿٨﴾

5 ការប្រៀបធៀបពួកដែលត្រូវបានគេដាក់បញ្ញាឱ្យអនុវត្តតាមគម្ពីរតៅរ៉ត ប៉ុន្តែពួកគេបោះបង់មិនអនុវត្តតាមវាគឺប្រៀបដូចជាសត្វលាដែលដឹកគម្ពីរដ៏ធំតែមិនដឹងថាជាអ្វី។តើវាជាគម្ពីរឬអ្វីផ្សេង ?នេះជាឧទាហរណ៍ដ៏អាក្រក់បំផុតសម្រាប់ពួកអ្នកបដិសេធចំពោះអាយ៉ាត់ៗរបស់អល់ឡោះ។ ហើយអល់ឡោះមិនចង្អុលបង្ហាញចំពោះក្រុមដែលបំពានឡើយ។

6 ចូរអ្នក( មូហាំម៉ាត់ )ពោលថាៈឱពួកយ៉ាហ៊ូទី !ប្រសិនបើពួកអ្នកអះអាងថាពួកអ្នកជាសំណព្វចិត្តរបស់អល់ឡោះពិសេសជាងមនុស្សដទៃនោះ។ចូរប្រាថ្នាសេចក្តីស្លាប់ចុះដើម្បីឆាប់បានទៅកាន់ឧត្តមភាពដូចដែលការអះអាងរបស់ពួកអ្នក។បើសិនជាការអះអាងជាការពិតមែនថាពួកអ្នកជាសំណព្វចិត្តរបស់អល់ឡោះពិសេសជាងមនុស្សដទៃនោះ។

7 ពួកគេមិនប្រាថ្នាសេចក្តីស្លាប់ជាដាច់ខាតផ្ទុយទៅវិញពួកគេប្រាថ្នាចង់រស់នៅលើ



លោកិយ៍នេះជាអមតៈដោយសារពួកគេបានប្រព្រឹត្តអំពើអជំនឿអំពើបាបនិងអំពើអយុត្តិធម៌។ការកែប្រែនិងផ្លាស់ប្តូរគម្ពីរតៅរ៉ត។អល់ឡោះជាម្ចាស់មហាដឹងអំពីពួកអ្នកដែលប្រព្រឹត្តអំពើអយុត្តិធម៌។គ្មានអ្វីអាចលាក់បាំងនឹងទ្រង់បានឡើយ។ហើយពួកគេនឹងទទួលបានការតបស្នងទៅតាមទង្វើរបស់ពួកគេ។

8 ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ពួកយ៉ាហ៊ូទថាៈ ពិតប្រាកដណាស់សេចក្តីស្លាប់ដែលពួកអ្នកខំគេចពីវាគឺវាពិតជានឹងជួបពួកអ្នកជាមិនខានទោះបីជាយូរឬឆាប់ក៏ដោយ។បន្ទាប់មកគេឱ្យពួកអ្នកវិលត្រលប់ទៅរកម្ចាស់ដ៏មហាដឹងនូវប្រការលាក់បាំង និងបើកចំហនៅថ្ងៃបរលោក។បន្ទាប់មកទៀត ទ្រង់នឹងប្រាប់នូវអ្វីដែលពួកអ្នកបានធ្វើនៅលើលោកិយ៍។ហើយពួកអ្នកនឹងទទួលបានការតបស្នងទៅតាមទង្វើរបស់ពួកអ្នក។

يَـٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا نُودِىَ لِلصَّلَوٰةِ مِن يَوْمِ ٱلْجُمُعَةِ فَٱسْعَوْاْ إِلَىٰ ذِكْرِ ٱللَّهِ وَذَرُواْ
ٱلْبَيْعَ ذَٰلِكُمْ خَيْرٌ لَّكُمْ إِن كُنتُمْ تَعْلَمُونَ ٩ فَإِذَا قُضِيَتِ ٱلصَّلَوٰةُ فَٱنتَشِرُواْ فِى
ٱلْأَرْضِ وَٱبْتَغُواْ مِن فَضْلِ ٱللَّهِ وَٱذْكُرُواْ ٱللَّهَ كَثِيرًا لَّعَلَّكُمْ تُفْلِحُونَ ١٠

9 ឱបណ្តាអ្នកដែលមានជំនឿ!ចូរប្រព្រឹត្តនូវអ្វីដែលគេបានកំណត់លើពួកអ្នក។នៅពេលមានគេអំពាវនាវពួកអ្នកឱ្យទៅស៊ឺឡាត់នៅថ្ងៃសុក្របន្ទាប់ពីអ៊ីម៉ាំឡើងលើមិម្ពើរ ចូរពួកអ្នកស្រវាន់ទៅកាន់ម៉ាស្ជិទដើម្បីស្តាប់ខុតបះនិងសឡាត។ចូរបោះបង់ការលក់ដូរកុំឱ្យមករំខានអ្នកក្នុងពេលប្រតិបត្តិ។កិច្ចការទាំងនោះគឺជាការប្រសើរបំផុតសម្រាប់ពួកអ្នក ប្រសិនបើពួកអ្នកបានដឹង។ចូរប្រតិបត្តិតាមអ្វីដែលអល់ឡោះបានបញ្ជារប្រើលើពួកអ្នក។

10 នៅពេលពួកអ្នកសឡាតថ្ងៃសុក្រនិងប្រតិបត្តិរួចរាល់។ចូរពួកអ្នកបំបែកគ្នានៅលើផែនដីនិងត្រូវស្វែងរកលាភសក្ការៈដែលហាឡាលដើម្បីបំពេញតម្រូវការពួកអ្នក។ចូបួងសួងពីអល់ឡោះឱ្យផ្តល់លាភសក្ការៈដែលហាឡាល។ហើយចូរពួកអ្នករំលឹកទៅចំពោះអល់ឡោះឱ្យបានច្រើនក្នុងពេលស្វែងរកលាភសក្ការៈ។កុំឱ្យការស្វែងរកលាភសក្ការៈរបស់ពួកអ្នកធ្វើឱ្យភ្លេចរំលឹកទៅចំពោះអល់ឡោះឱ្យសោះ។សង្ឃឹមថាពួកអ្នកនឹងទទួលបានជោគជ័យ។

وَإِذَا رَأَوْاْ تِجَٰرَةً أَوْ لَهْوًا ٱنفَضُّوٓاْ إِلَيْهَا وَتَرَكُوكَ قَآئِمًا قُلْ مَا عِندَ ٱللَّهِ خَيْرٌ مِّنَ ٱللَّهْوِ
وَمِنَ ٱلتِّجَٰرَةِ وَٱللَّهُ خَيْرُ ٱلرَّٰزِقِينَ ١١

11 នៅពេលដែលពួកគេឃើញការជួញដូរឬការកម្សាន្តសប្បាយពួកគេបានបំបែកគ្នាទៅរកវាដោយពួកគេបោះបង់ចោលអ្នក(មូហាំម៉ាត់)ឱ្យនៅឈរ(ស៊ូត្រខុតហ្ពះ)តែម្នាក់ឯង។ចូរអ្នក(មូហាំម៉ាត់)ពោលថាៈអ្វីដែលនៅជាមួយអល់ឡោះអំពីរង្វាន់នៃការប្រព្រឹត្តទង្វើកុសលគឺប្រសើរជាងការលេងសប្បាយនិងជំនួញទៅទៀត។ហើយអល់ឡោះជាអ្នកផ្តល់លាភសក្ការៈដ៏ប្រសើរបំផុត។

## អាល់មូណាហ្វីគូន

**គោលបំណងនៃស៊ូរ៉ោះ** ការបកអាក្រាតពីពួកពុតត្បុត(ម៉ូណាហ្វីក)និងលក្ខណៈសម្បត្តិរបស់ពួកវានិងបង្ហាញពីគោលជំហររបស់ពួកគេអំពីឥស្លាម។ហើយផ្តល់ការប្រុងប្រយ័ត្នអំពីពួកគេនិងប្រដូចទៅនឹងពួកគេ។

**តាហ្សៀរ**

إِذَا جَآءَكَ ٱلْمُنَٰفِقُونَ قَالُواْ نَشْهَدُ إِنَّكَ لَرَسُولُ ٱللَّهِ ۗ وَٱللَّهُ يَعْلَمُ إِنَّكَ لَرَسُولُهُۥ وَٱللَّهُ يَشْهَدُ إِنَّ





ٱلْمُنَٰفِقِينَ لَكَٰذِبُونَ ١ ٱتَّخَذُوٓاْ أَيْمَٰنَهُمْ جُنَّةً فَصَدُّواْ عَن سَبِيلِ ٱللَّهِ ۚ إِنَّهُمْ سَآءَ مَا
كَانُواْ يَعْمَلُونَ ٢ ذَٰلِكَ بِأَنَّهُمْ ءَامَنُواْ ثُمَّ كَفَرُواْ فَطُبِعَ عَلَىٰ قُلُوبِهِمْ فَهُمْ لَا يَفْقَهُونَ ٣
وَإِذَا رَأَيْتَهُمْ تُعْجِبُكَ أَجْسَامُهُمْ ۖ وَإِن يَقُولُواْ تَسْمَعْ لِقَوْلِهِمْ ۖ كَأَنَّهُمْ خُشُبٌ مُّسَنَّدَةٌ
يَحْسَبُونَ كُلَّ صَيْحَةٍ عَلَيْهِمْ ۚ هُمُ ٱلْعَدُوُّ فَٱحْذَرْهُمْ ۚ قَٰتَلَهُمُ ٱللَّهُ ۖ أَنَّىٰ يُؤْفَكُونَ ٤

1 នៅពេលដែលពួកពុតត្បុតបានមកចូលរួមក្នុងការជួបជុំរបស់អ្នក ( មូហាំម៉ាត់ ) ពួកគេបង្ហាញថាគេជឿជាក់ស្មោះនឹងលាក់បាំងពីភាពការហៀវ។ពួកគេបាននិយាយថាៈ ពួកយើងធ្វើជាសាក្សីថាពិតប្រាកដណាស់អ្នកគឺជាអ្នកនាំសាររបស់អល់ឡោះ។អល់ឡោះទ្រង់ដឹងច្បាស់ថាអ្នកជារ៉ស៊ូលុលឡោះរបស់អល់ឡោះ។អល់ឡោះទ្រង់អះអាងថាពួកមូណាហ្វិគីនកុហកប្រាកប្រាស់។ក្នុងការអះអាងរបស់ពួកគេថា មូហាំម៉ាត់ជារ៉ស៊ូលុលឡោះស្តែងចេញពីទឹកចិត្តស្មោះសរបស់ពួកគេ។

2 ពួកគេបានយកការស្បថបំពានរបស់ពួកគេធ្វើជាខែលដើម្បីការពារខ្លួនទ្រព្យសម្បត្តិនិងកូនចៅរបស់ពួកគេ។ពួកគេហាមឃាត់មនុស្សមិនឱ្យមានជំនឿដោយសារការមន្ទិលសង្ស័យនិងការស្អប់ខ្ពើមរបស់ពួកគេ។ពិតណាស់ទង្វើដែលពួកគេបានធ្វើអំពើពុតត្បុតនិងការស្បថបំពានជាទង្វើដ៏អាក្រក់ជាទីបំផុត។

3 នោះគឺដោយសារតែពួកគេមានជំនឿពុតត្បុតដែលមិនមែនជាជំនឿចេញពីដួងចិត្តស្មោះរបស់ពួកគេ។បន្ទាប់មកពួកគេបានប្រឆាំងនឹងអល់ឡោះលាក់បាំងវិញ។ដូច្នេះហើយគេបានបោះត្រាភ្ជិតលើដួងចិត្តរបស់ពួកគេដោយសារភាពអជំនឿរបស់ពួកគេ។ពួកគេលែងយល់ប្រការល្អនិងសេចក្តីចង្អុលបង្ហាញ។

4 នៅពេលពួកអ្នកឃើញពួកគេរាងកាយនិងឋានៈស័ក្តិរបស់ពួកគេធ្វើឱ្យពួកអ្នកភ្ញាក់ផ្អើលដោយសារភពស្រស់ស្អាតនិងសមរម្យ។បើសិនជាពួកគេនិយាយអ្នកស្តាប់សម្តីរបស់ពួកគេដោយសារពាក្យសម្តីដ៏ប៉ិនប្រសប់និងថ្វីមាត់របស់ពួកគេ។ពួកគេអង្គុយជុំគ្នាជាមួយនឹងរ៉ស៊ូលលុលឡោះក៏ប៉ុន្តែពួកគេប្រៀបដូចជាកំណាត់ឈើដែលគេផ្អែកចោលនៅក្បែរជញ្ជាំង។ដែលមិនយល់មិនដឹងអ្វីទាំងអស់។ពួកគេគិតថាគ្រប់សំឡេងស្រែកទាំងឡាយគឺសំដៅទៅលើពួកគេ។ពួកគេជាសត្រូវនឹងអ្នក។ដូច្នេះចូរអ្នកប្រុងប្រយ័ត្នចំពោះពួកគេ។កុំឱ្យធក់យកឱកាសពីអ្នកឬកុំឱ្យពួកគេលួចស៊ើបដំណឹងអាថ៌កំបាំងរបស់អ្នក។អល់ឡោះនឹងដាក់បណ្តាសាពួកគេ។ហេតុអ្វីបានជាពួកគេងាកចេញពីជំនឿពិតហើយងាកទៅរកកំហុសទៅវិញ។

وَإِذَا قِيلَ لَهُمْ تَعَالَوْاْ يَسْتَغْفِرْ لَكُمْ رَسُولُ ٱللَّهِ لَوَّوْاْ رُءُوسَهُمْ وَرَأَيْتَهُمْ يَصُدُّونَ وَهُم
مُّسْتَكْبِرُونَ ٥ سَوَآءٌ عَلَيْهِمْ أَسْتَغْفَرْتَ لَهُمْ أَمْ لَمْ تَسْتَغْفِرْ لَهُمْ لَن يَغْفِرَ ٱللَّهُ
لَهُمْ ۚ إِنَّ ٱللَّهَ لَا يَهْدِى ٱلْقَوْمَ ٱلْفَٰسِقِينَ ٦ هُمُ ٱلَّذِينَ يَقُولُونَ لَا تُنفِقُواْ عَلَىٰ مَنْ
عِندَ رَسُولِ ٱللَّهِ حَتَّىٰ يَنفَضُّواْ ۗ وَلِلَّهِ خَزَآئِنُ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ وَلَٰكِنَّ ٱلْمُنَٰفِقِينَ
لَا يَفْقَهُونَ ٧ يَقُولُونَ لَئِن رَّجَعْنَآ إِلَى ٱلْمَدِينَةِ لَيُخْرِجَنَّ ٱلْأَعَزُّ مِنْهَا ٱلْأَذَلَّ ۚ
وَلِلَّهِ ٱلْعِزَّةُ وَلِرَسُولِهِۦ وَلِلْمُؤْمِنِينَ وَلَٰكِنَّ ٱلْمُنَٰفِقِينَ لَا يَعْلَمُونَ ٨

5 ហើយនៅពេលមានគេនិយាយទៅកាន់ពួកគេ ( ពួកពុតត្បុត ) ថាៈចូរពួកអ្នកនាំគ្នាមកអ្នកនាំសាររបស់អល់ឡោះ ( មូហាំម៉ាត់ ) នឹងសុំអភ័យទោសឱ្យពួកអ្នក។លោកនឹងសុំអភ័យទោសពីព្រះអល់ឡោះឱ្យពួកអ្នកនូវបាបកម្មរបស់ពួកអ្នក។ពួកគេបែរជាគ្រវីក្បាល



របស់ពួកគេសម្តែងឫកពារមើលងាយទៅវិញ។ពួកគេងាកចេញពីរ៉សូលុលទ្បោះ។ពួកក្រអឺតក្រទមមិនព្រមមកជួបរ៉សូលុលឡោះនិងសុំឱ្យគាត់បួងសួងសុំអភ័យទោសឱ្យ។

6 វាដូចតែគ្នាទេចំពោះពួកគេទោះបីជាអ្នកបានសុំអភ័យទោសឱ្យពួកគេឬមិនបានសុំអភ័យទោសឱ្យពួកគេក៏ដោយក៏អល់ឡោះមិនអភ័យទោសឱ្យពួកគេដែរ។ពិតណាស់អល់ឡោះទ្រង់មិនចង្អុលបង្ហាញផ្លូវចំពោះក្រុមដែលប្រាសចាកពីការប្រតិបត្តិនិងងុបងល់នឹងអំពើបទល្មើសឡើយ។

7 ពួកគេនេះឯងដែលនិយាយថាចូរកុំបរិច្ចាគលុយឱ្យពួកអ្នកដែលនៅជាមួយនឹងរ៉សូលុលឡោះដើម្បីឱ្យពួកគេរត់ចេញពីណាពី។ឃ្លាំងទ្រព្យនៅលើមេឃនិងនៅលើផែនដីជាកម្មសិទ្ធិរបស់អល់ឡោះ។ទ្រង់ជាអ្នកប្រទានលាភសក្ការៈដល់អ្នកដែលទ្រង់ពេញចិត្តអំពីខ្ញុំរបស់ទ្រង់។ក៏ប៉ុន្តែពួកមូណាហ្វិគីនមិនយល់នោះទេថាឃ្លាំងលាភសក្ការៈគឺស្ថិតនៅក្នុងកណ្តាប់ដៃរបស់អល់ឡោះ។

8 មេខ្លោងរបស់ពួកគេគឺអាប់ឌុលឡោះពីនអ៊ូបៃបាននិយាយថាៈបើសិនជាពួកយើងបានត្រលប់ទៅម៉ាឌីណះវិញពួកអ្នកថ្លៃថ្នូរ(គេហើយនិងក្រុមរបស់គេ)នឹងដេញពួកអ្នកអាប់ឱនចេញពីម៉ាឌីណះ(មូហាំម៉ាត់នឹងក្រុមរបស់លោក)។ខណៈដែលភាពខ្លាំងពូកែជាកម្មសិទ្ធិរបស់អល់ឡោះនឹងអ្នកនាំសាររបស់ទ្រង់ព្រមទាំងជាកម្មសិទ្ធិរបស់បណ្តាអ្នកដែលមានជំនឿប៉ុណ្ណោះ។វាមិនមែនជាកម្មសិទ្ធរបស់អាប់ឌុលឡោះពីនអ៊ូបៃនិងក្រុមរបស់គេឡើយ។ប៉ុន្តែពួកពុតត្បុតមិនដឹងថាភាពខ្លាំងពូកែជាកម្មសិទ្ធិរបស់អល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ព្រមទាំងជាកម្មសិទ្ធិរបស់បណ្តាអ្នកដែលមានជំនឿឡើយ។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ لَا تُلۡهِكُمۡ أَمۡوَٰلُكُمۡ وَلَآ أَوۡلَٰدُكُمۡ عَن ذِكۡرِ ٱللَّهِۚ وَمَن
يَفۡعَلۡ ذَٰلِكَ فَأُوْلَٰٓئِكَ هُمُ ٱلۡخَٰسِرُونَ ٩ وَأَنفِقُواْ مِن مَّا رَزَقۡنَٰكُم مِّن قَبۡلِ أَن يَأۡتِيَ
أَحَدَكُمُ ٱلۡمَوۡتُ فَيَقُولَ رَبِّ لَوۡلَآ أَخَّرۡتَنِيٓ إِلَىٰٓ أَجَلٖ قَرِيبٖ فَأَصَّدَّقَ وَأَكُن مِّنَ
ٱلصَّٰلِحِينَ ١٠ وَلَن يُؤَخِّرَ ٱللَّهُ نَفۡسًا إِذَا جَآءَ أَجَلُهَاۚ وَٱللَّهُ خَبِيرُۢ بِمَا تَعۡمَلُونَ ١١

9 ឱបណ្តាអ្នកដែលមានជំនឿ!ចូរអនុវត្តិនូវអ្វីដែលគេបានកំណត់មកលើអ្នក។ចូរកុំឱ្យទ្រព្យសម្បត្តិរបស់ពួកអ្នកនិងកូនចៅរបស់ពួកអ្នកធ្វើឱ្យពួកអ្នកងប់ងុលឃ្លាតឆ្ងាយពីការរំលឹកទៅចំពោះអល់ឡោះឬកាតព្វកិច្ចសាសនាផ្សេងទៀតឱ្យសោះ។នរណាហើយដែលឱ្យទ្រព្យសម្បត្តិរបស់ពួកគេនិងកូនចៅរបស់ពួកគេធ្វើឱ្យពួកគេងប់ងុលឃ្លាតឆ្ងាយពីការរំលឹកទៅចំពោះអល់ឡោះនោះពួកគេគឺជាពួកអ្នកដែលខាតបង់ដ៏ធំធេងជាទីបំផុត។គឺជាពួកអ្នកដែលខាតបង់ទាំងខ្លួនរបស់វានិងក្រុមគ្រួសាររបស់វានៅថ្ងៃគីយ៉ាម៉ាត់។

10 ហើយចូរពួកអ្នកបរិច្ចាគមួយចំនួនអំពីលាភសក្ការៈដែលអល់ឡោះបានផ្តល់ឱ្យពួកអ្នកមុននឹងសេចក្តីស្លាប់មកដល់អ្នកណាម្នាក់ក្នុងចំណោមពួកអ្នក។ហើយគេក៏បាននិយាយទៅកាន់ម្ចាស់របស់គេថាៈ ឱម្ចាស់របស់ខ្ញុំ!ប្រសិនបើទ្រង់ពន្យារពេលឱ្យខ្ញុំបន្តិចទៀតនោះខ្ញុំពិតជាបរិច្ចាគទានអំពីទ្រព្យសម្បត្តិរបស់ខ្ញុំក្នុងមាគ៌ាអល់ឡោះហើយខ្ញុំនឹងស្ថិតក្នុងចំណោមអ្នកដែលសាងអំពើល្អត្រឹមត្រូវជាមិនខាន។

11 ហើយអល់ឡោះនឹងមិនពន្យារពេលឱ្យបុគ្គលណាម្នាក់ឡើយនៅពេលដែលសេចក្តីស្លាប់បានមកដល់គេហើយនោះ។ហើយអល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។គ្មានទង្វើអ្វីអាចលាក់បាំងទ្រង់បានឡើយ។ហើយទ្រង់នឹងតបស្នងនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។ប្រសិនបើល្អនឹងទទួលបានល្អប្រសិនបើអាក្រក់នឹងទទួលបានអាក្រក់។





# អាត់តាហ្គុន

**គោលបំណងនៃសូរ៉ោះ**ការរំលឹកពីភាពខាតបង់របស់ពួកកើហ្វៀរនៅក្នុងថ្ងៃគីយ៉ាម៉ាត់។ហើយព្រមានពីភាពអជំនឿនឹងក្រុមរបស់វា។

**តាហ្វសៀរ**

يُسَبِّحُ لِلَّهِ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلْأَرْضِۖ لَهُ ٱلْمُلْكُ وَلَهُ ٱلْحَمْدُۖ وَهُوَ عَلَىٰ كُلِّ شَيْءٍ قَدِيرٌ
١ هُوَ ٱلَّذِي خَلَقَكُمْ فَمِنكُمْ كَافِرٌ وَمِنكُم مُّؤْمِنٌۚ وَٱللَّهُ بِمَا تَعْمَلُونَ بَصِيرٌ ٢ خَلَقَ
ٱلسَّمَٰوَٰتِ وَٱلْأَرْضَ بِٱلْحَقِّ وَصَوَّرَكُمْ فَأَحْسَنَ صُوَرَكُمْۖ وَإِلَيْهِ ٱلْمَصِيرُ ٣ يَعْلَمُ مَا فِي
ٱلسَّمَٰوَٰتِ وَٱلْأَرْضِ وَيَعْلَمُ مَا تُسِرُّونَ وَمَا تُعْلِنُونَۚ وَٱللَّهُ عَلِيمٌۢ بِذَاتِ ٱلصُّدُورِ ٤

(1) អល់ឡោះទ្រង់ជ្រះស្អាតពីលក្ខណសម្បត្តិដែលខ្វះខាត។ហើយអ្វីដែលមាននៅលើមេឃជាច្រើនជាន់និងអ្វីដែលមាននៅលើផែនដីលើកតម្កើងចំពោះអល់ឡោះ។អំណាចគ្រប់គ្រងគឺជាកម្មសិទ្ធិរបស់ទ្រង់គ្មានអ្នកណាអាចគ្រប់គ្រងបានឡើយហើយរាល់ការសរសើរក៏ជាកម្មសិទ្ធិរបស់ទ្រង់ដែរ។ ហើយទ្រង់មានអានុភាពលើអ្វីៗទាំងអស់។

(2) ទ្រង់ជាអ្នកដែលបានបង្កើតពួកអ្នក។ហើយពួកអ្នកមួយចំនួនជាអ្នកគ្មានជំនឿហើយដំណើរពួកគេឆ្ពោះទៅរកឋាននរក។និងមួយចំនួនទៀតជាអ្នកមានជំនឿហើយដំណើរពួកគេឆ្ពោះទៅរកឋានសួគ៌។ហើយអល់ឡោះឃើញបំផុតនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។គ្មានទង្វើរបស់ពួកអ្នកណាមួយអាចលាក់បាំងទ្រង់បានឡើយ។ហើយទ្រង់នឹងតបស្នងទៅតាមអ្វីដែលពួកអ្នកបានប្រព្រឹត្ត។

(3) ទ្រង់បានបង្កើតមេឃជាច្រើនជាន់និងផែនដីដោយពិតប្រាកដហើយទ្រង់បានបង្កើតរូបរាងពួកអ្នកនិងបានធ្វើឱ្យរូបរាងរបស់ពួកអ្នកល្អស្អាត។ប្រសិនបើទ្រង់ចង់ទ្រង់អាចធ្វើឱ្យវាអាក្រក់បាន។ហើយចំពោះទ្រង់តែមួយគត់ដែលត្រូវវិលត្រឡប់។ ហើយទ្រង់នឹងតបស្នងឱ្យពួកអ្នកទៅតាមអ្វីដែលពួកអ្នកបានប្រព្រឹត្ត។បើល្អនឹងទទួលបានល្អបើអាក្រក់នឹងទទួលបានអាក្រក់។

(4) ទ្រង់ដឹងបំផុតនូវអ្វីដែលមាននៅលើមេឃជាច្រើនជាន់និងនៅលើផែនដី។ហើយទ្រង់ក៏ដឹងបំផុតនូវទង្វើដែលពួកអ្នកលាក់បាំងនិងអ្វីដែលពួកអ្នកលាតត្រដាងដែរ។ ហើយអល់ឡោះដឹងបំផុតនូវអ្វីដែលមាននៅក្នុងចិត្តអំពីប្រការល្អឬអាក្រក់។គ្មានអ្វីអាចលាក់បាំងទ្រង់បានឡើយ។

(5) តើដំណឹងរបស់ពួកដែលប្រឆាំងកាលពីមុនមិនបានមកដល់ពួកអ្នកទេឬ ?ដូចជាពួកណូហ៍ អាត់ សាមូតនិងអ្នកផ្សេងទៀត។ពួកគេបានភ្លក្សនូវលទ្ធផលចុងក្រោយដ៏អាក្រក់របស់ពួកគេនៅលើលោកិយ។ហើយពួកគេនឹងទទួលទារុណកម្មដ៏សែនឈឺចាប់នៅថ្ងៃបរលោក។ពិតណាស់!ដំណឹងនោះបានមកដល់ពួកអ្នក។ចូរពិចារណាលើកិច្ចការពួកគេនោះ។ហើយចូរទទួលសារភាពកំហុសទៅចំពោះអល់ឡោះមុនពេលដែលពួកអ្នកទទួលបានដូចអ្វីដែលពួកគេទទួលបាន។

أَلَمْ يَأْتِكُمْ نَبَؤُا۟ ٱلَّذِينَ كَفَرُوا۟ مِن قَبْلُ فَذَاقُوا۟ وَبَالَ أَمْرِهِمْ وَلَهُمْ عَذَابٌ أَلِيمٌ ٥ ذَٰلِكَ بِأَنَّهُۥ كَانَت
تَّأْتِيهِمْ رُسُلُهُم بِٱلْبَيِّنَٰتِ فَقَالُوٓا۟ أَبَشَرٌ يَهْدُونَنَا فَكَفَرُوا۟ وَتَوَلَّوا۟ۚ وَّٱسْتَغْنَى ٱللَّهُۚ وَٱللَّهُ غَنِيٌّ حَمِيدٌ ٦

(6) ទារុណកម្មដែលពួកគេទទួលនោះគឺដោយសារតែបណ្ដាអ្នកនាំសាររបស់ពួកគេបាននាំភស្តុតាងដ៏ច្បាស់លាស់ជាច្រើនមកដល់ពួកគេតែពួកគេបែរជានិយាយទាំងបដិសេធថាគ្រាន់តែជាមនុស្សធម្មតាអាចចង្អុលបង្ហាញពួកយើងបានដែរឬ ?ហើយ

ពួកគេក៏បានប្រឆាំងនិងបានបែរចេញ(ពីការពិត)។គ្មានអ្វីប៉ះពាល់ដល់អល់ឡោះ
ឡើយ។ហើយអល់ឡោះទ្រង់មិនត្រូវការជំនឿនិងការសក្ការៈរបស់ពួកគេនោះទេ។
ព្រោះការសក្ការៈរបស់ពួកគេមិនបានបន្ថែមអ្វីឡើយ។ហើយអល់ឡោះមហាមាន
លើសលុបជាទីគោរពសរសើរបំផុតដោយពាក្យសំដី និងរូបភាពផ្សេងៗ។
7 ពួកដែលប្រឆាំងបានគិតថាពួកគេនឹងមិនត្រូវបានគេធ្វើឱ្យរស់ឡើងវិញឡើយ។
ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់អ្នកដែលបដិសេធមិនមានការរស់ឡើងវិញថាអល់
ឡោះនឹងបង្កើតឱ្យពួកអ្នលរស់ឡើងវិញម្តងទៀតក្រោយពេលស្លាប់។បន្ទាប់មកពួក
អ្នកនឹងត្រូវគេប្រាប់ឱ្យដឹងនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្តនៅលើលោកិយ៍។ហើយ
ទាំងនោះគឺជាការងាយស្រួលបំផុតចំពោះអល់ឡោះ។ពិតណាស់ទ្រង់បានបង្កើតពួក
អ្នកតាំងពីលើកដំបូងហើយទ្រង់មានលទ្ធភាពអាចឱ្យពួកអ្នលរស់ឡើងវិញម្តងទៀត
ក្រោយពេលស្លាប់ដើម្បីជំនុំជំរះ។

زَعَمَ ٱلَّذِينَ كَفَرُوٓاْ أَن لَّن يُبۡعَثُواْۚ قُلۡ بَلَىٰ وَرَبِّي لَتُبۡعَثُنَّ ثُمَّ لَتُنَبَّؤُنَّ بِمَا عَمِلۡتُمۡۚ وَذَٰلِكَ عَلَى ٱللَّهِ
يَسِيرٞ ٧ فَـَٔامِنُواْ بِٱللَّهِ وَرَسُولِهِۦ وَٱلنُّورِ ٱلَّذِيٓ أَنزَلۡنَاۚ وَٱللَّهُ بِمَا تَعۡمَلُونَ خَبِيرٞ ٨ يَوۡمَ يَجۡمَعُكُمۡ
لِيَوۡمِ ٱلۡجَمۡعِۖ ذَٰلِكَ يَوۡمُ ٱلتَّغَابُنِۗ وَمَن يُؤۡمِنۢ بِٱللَّهِ وَيَعۡمَلۡ صَٰلِحٗا يُكَفِّرۡ عَنۡهُ سَيِّـَٔاتِهِۦ وَيُدۡخِلۡهُ
جَنَّٰتٖ تَجۡرِي مِن تَحۡتِهَا ٱلۡأَنۡهَٰرُ خَٰلِدِينَ فِيهَآ أَبَدٗاۚ ذَٰلِكَ ٱلۡفَوۡزُ ٱلۡعَظِيمُ ٩ وَٱلَّذِينَ
كَفَرُواْ وَكَذَّبُواْ بِـَٔايَٰتِنَآ أُوْلَٰٓئِكَ أَصۡحَٰبُ ٱلنَّارِ خَٰلِدِينَ فِيهَاۖ وَبِئۡسَ ٱلۡمَصِيرُ

8 ហើយចូរពួកអ្នក(មនុស្សទាំងឡាយ)មានជំនឿលើអល់ឡោះនិងអ្នកនាំសាររបស់
ទ្រង់(មូហាំម៉ាត់)ហើយនឹងគម្ពីរគួរអានដែលយើងបានបញ្ចុះមកលើអ្នកនាំសាររបស់
យើង។ហើយអល់ឡោះដឹងជ្រួតជ្រាបនូវអ្វីដែលពួកអ្នកប្រព្រឹត្ត។គ្មានអ្វីអាចលាក់បាំង
ទ្រង់បានឡើយ។ហើយទ្រង់នឹងតបស្នងទៅតាមអ្វីដែលពួកអ្នកបានប្រព្រឹត្ត។
9 ចូរចងចាំ(មនុស្សទាំងឡាយ)នៅថ្ងៃដែលទ្រង់នឹងប្រមូលផ្តុំពួកអ្នកនៅថ្ងៃគីយ៉ា
ម៉ាត់ដើម្បីជំនុំជំរះនូវទង្វើរបស់ពួកអ្នក។នោះគឺជាថ្ងៃដែលស្តែងចេញពីភាពខាតបង់
របស់ពួកដែលប្រឆាំងខណៈដែលអ្នកមានជំនឿទទួលបានមរត្តកគេហដ្ឋានរបស់អ្នក
ប្រឆាំងនៅក្នុងឋានសួគ៌ហើយអ្នកប្រឆាំងទទួលបានមរត្តកគេហដ្ឋានរបស់អ្នកមាន
ជំនឿនៅក្នុងឋាននរក៍។អ្នកណាដែលមានជំនឿនឹងអល់ឡោះហើយបានសាងអំពើ
ល្អត្រឹមត្រូវនោះទ្រង់នឹងលុបបំបាត់ពីគេនូវបាបកម្មទាំងឡាយរបស់គេនិងបញ្ចូលគេ
ទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវាដោយពួកគេស្ថិតនៅក្នុងនោះ
ជាអមតៈ។ដោយគ្មានការចាកចេញឬកាត់ផ្តាច់លាភសក្ការៈឡើយ។ហើយអ្វីដែល
ពួកគេទទួលបាននោះគឺជាជោគជ័យមួយដ៏ធំបំផុត។
10 រីឯពួកដែលប្រឆាំងនឹងអល់ឡោះនិងបានបដិសេធនឹងភស្តុតាងៗរបស់យើង
ដែលបានបញ្ចុះមកឱ្យអ្នកនាំសារពួកទាំងនោះគឺជាពួកអ្នកឋាននរកដោយពួកគេ
ស្ថិតនៅក្នុងនោះជាអមតៈនិងជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុតរបស់ពួកគេ។

مَآ أَصَابَ مِن مُّصِيبَةٍ إِلَّا بِإِذۡنِ ٱللَّهِۗ وَمَن يُؤۡمِنۢ بِٱللَّهِ يَهۡدِ قَلۡبَهُۥۚ وَٱللَّهُ بِكُلِّ
شَيۡءٍ عَلِيمٞ ١١ وَأَطِيعُواْ ٱللَّهَ وَأَطِيعُواْ ٱلرَّسُولَۚ فَإِن تَوَلَّيۡتُمۡ فَإِنَّمَا عَلَىٰ رَسُولِنَا
ٱلۡبَلَٰغُ ٱلۡمُبِينُ ١٢ ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَۚ وَعَلَى ٱللَّهِ فَلۡيَتَوَكَّلِ ٱلۡمُؤۡمِنُونَ ١٣

11 គ្មានអ្នកណាម្នាក់ទទួលរងគ្រោះថ្នាក់ឡើយនៅលើខ្លួនវានៅលើទ្រព្យសម្បត្តិវា
នៅលើកូនចៅវាលើកលែងតែជាការកំណត់របស់អល់ឡោះ។ហើយអ្នកណាដែល




មានជំនឿលើការកំណត់របស់អល់ឡោះទ្រង់នឹងចង្អុលបង្ហាញដល់ដួងចិត្តរបស់គេ
ឱ្យព្រមទទួលយកកិច្ចការនិងការកំណត់នោះ។ហើយអល់ឡោះដឹងបំផុតនូវអ្វីៗទាំង
អស់។គ្មានអ្វីអាចលាក់បាំងទ្រង់ឡើយ។
(12) ហើយចូរពួកអ្នកប្រតិបត្តិតាមអល់ឡោះនិងប្រតិបត្តិតាមអ្នកនាំសារ(មូហាំម៉ាត់)
។តែប្រសិនបើពួកអ្នកងាកចេញពីអ្វីដែលអ្នកនាំសារបាននាំមកនោះពិតណាស់ពួកអ្នក
នឹងទទួលបាបកម្មពីការការងាកចេញនោះ។ហើយពិតប្រាកដណាស់កាតព្វកិច្ចអ្នកនាំ
សាររបស់យើងគ្រាន់តែជាអ្នកផ្សព្វផ្សាយសារដ៏ច្បាស់លាស់ប៉ុណ្ណោះ។ហើយគាត់ពិតជា
បានផ្សព្វផ្សាយសារដល់ពួកអ្នកនូវអ្វីដែលគេបានប្រើឱ្យគាត់ផ្សព្វផ្សាយវាហើយ។
(13) អល់ឡោះជាម្ចាស់ដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដគ្មានម្ចាស់ណាត្រូវគេ
គោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ។ហើយចំពោះអល់ឡោះតែមួយគត់
ដែលបណ្ដាអ្នកមានជំនឿប្រគល់ការទុកចិត្ត។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِنَّ مِنْ أَزْوَٰجِكُمْ وَأَوْلَٰدِكُمْ عَدُوًّا لَّكُمْ فَٱحْذَرُوهُمْ
وَإِن تَعْفُواْ وَتَصْفَحُواْ وَتَغْفِرُواْ فَإِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ ﴿١٤﴾ إِنَّمَآ أَمْوَٰلُكُمْ
وَأَوْلَٰدُكُمْ فِتْنَةٌ وَٱللَّهُ عِندَهُۥٓ أَجْرٌ عَظِيمٌ ﴿١٥﴾ فَٱتَّقُواْ ٱللَّهَ مَا ٱسْتَطَعْتُمْ وَٱسْمَعُواْ
وَأَطِيعُواْ وَأَنفِقُواْ خَيْرًا لِّأَنفُسِكُمْ وَمَن يُوقَ شُحَّ نَفْسِهِۦ فَأُوْلَٰٓئِكَ هُمُ
ٱلْمُفْلِحُونَ ﴿١٦﴾ إِن تُقْرِضُواْ ٱللَّهَ قَرْضًا حَسَنًا يُضَٰعِفْهُ لَكُمْ وَيَغْفِرْ لَكُمْ وَٱللَّهُ
شَكُورٌ حَلِيمٌ ﴿١٧﴾ عَٰلِمُ ٱلْغَيْبِ وَٱلشَّهَٰدَةِ ٱلْعَزِيزُ ٱلْحَكِيمُ ﴿١٨﴾

(14) ឱបណ្ដាអ្នកដែលមានជំនឿចំពោះអល់ឡោះ!ពិតប្រាកដណាស់ភរិយារបស់ពួក
អ្នកនិងកូនចៅរបស់ពួកអ្នកមួយចំនួនជាសត្រូវរបស់ពួកអ្នក។ដោយការរំខានអ្នកមិនឱ្យ
អ្នកនឹករលឹកចំពោះអល់ឡោះនិងការធ្វើជីហាតក្នុងផ្លូវអល់ឡោះ។ដូច្នេះចូរពួកអ្នកប្រុង
ប្រយ័ត្នចំពោះពួកគេ។ប៉ុន្តែបើពួកអ្នកអធ្យាស្រ័យនិងសណ្ដោសប្រណីហើយនិងអភ័យ
ទោសដល់ពួកគេនោះគឺពិតប្រាកដណាស់អល់ឡោះមហាអភ័យទោសមហាអាណិត
ស្រឡាញ់ដល់ពួកអ្នក។ហើយការតបស្នងគឺស្របទៅតាមការប្រព្រឹត្ត។
(15) តាមពិតទ្រព្យសម្បត្តិនិងកូនចៅរបស់ពួកអ្នកគឺគ្រាន់តែជាការសាកល្បងចំពោះ
ពួកអ្នកប៉ុណ្ណោះ។ការសាកល្បងនេះអូសទាញពួកអ្នកទៅប្រព្រឹត្តអំពើបាបនិងមិន
បំពេញសិទ្ធិរបស់អល់ឡោះ។ហើយអល់ឡោះមានការតបស្នងផលបុណ្យដ៏ធំធេង
ចំពោះអ្នកដែលបំពេញសិទ្ធអល់ឡោះនិងបោះបង់ការអូសទាញពីកូនចៅនិងទ្រព្យ
សម្បត្តិហើយការតបស្នងដ៏ធំធេងនោះគឺឋានសួគ៌។
(16) ដូច្នេះចូរពួកអ្នកកោតខ្លាចអល់ឡោះដោយគោរពតាមបទបញ្ជារទ្រង់និងជៀសវាង
ប្រការដែលទ្រង់ហាមឃាត់ទៅតាមលទ្ធភាពរបស់ពួកអ្នក។ហើយចូរពួកអ្នកស្ដាប់និង
ប្រតិបត្តិតាមអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់។ហើយនិងបរិច្ចាគទ្រព្យសម្បត្តិដែលទ្រង់
បានផ្ដល់ដល់អ្នកលើផ្លូវត្រឹមត្រូវ។ អ្នកណាហើយដែលរក្សាខ្លួនចេញពីភាពកំណាញ់ អ្នក
ទាំងនោះគឺជាអ្នកដែលទទួលបានជោគជ័យនិងទទួលបានជ័យជំនះពីភាពភ័យខ្លាច។
(17) ប្រសិនបើពួកអ្នកឱ្យអល់ឡោះខ្ចីនូវកម្ចីមួយដ៏ល្អប្រពៃដោយការបរិច្ចាគទ្រព្យស
ម្បត្តិក្នុងមាគ៌ាអល់ឡោះនោះទ្រង់នឹងបន្ថែមវាសម្រាប់ពួកអ្នកវិញទ្វេដងដោយប្រការ
ល្អមួយស្មើនឹងដប់ហើយកើនទៅដល់ប្រាំពីររយនឹងចេះតែកើនឡើងកាន់តែច្រើន។
ហើយទ្រង់នឹងអភ័យទោសនូវកំហុសឆ្គងពួកអ្នក។ហើយអល់ឡោះមហាដឹងគុណ
ទ្រង់ផ្ដល់ឱ្យកិច្ចតិចតួចទទួលបានផលច្រើន។ហើយទ្រង់មហាទន់ភ្លន់មិនប្រញាប់

ដាក់ទារុណកម្មឡើយ។
(18) អល់ឡោះទ្រង់ជាអ្នកដឹងបំផុតនូវភាពអាថ៌កំបាំងនិងភាពលាតត្រដាង។គ្មានអ្វី
លាក់បាំងនឹងទ្រង់បានឡើយ។ទ្រង់មហាមខ្លាំងពូកែមហាគតិបណ្ឌិត។

# អាត់តឡាគ

**គោលបំណងនៃស៊ូរ៉ោះ**លើកដំកើងកិច្ចការលែងលះនិងព្រំដែនរបស់វា។ហើយ
បញ្ជាក់ពីលទ្ធផលចុងក្រោយនៃការកោតខ្លាចនិងការបំពានលើព្រំដែនអល់ឡោះ។

**តាហ្វសៀរ**

يَٰٓأَيُّهَا ٱلنَّبِيُّ إِذَا طَلَّقۡتُمُ ٱلنِّسَآءَ فَطَلِّقُوهُنَّ لِعِدَّتِهِنَّ وَأَحۡصُواْ ٱلۡعِدَّةَۖ وَٱتَّقُواْ ٱللَّهَ رَبَّكُمۡۖ لَا
تُخۡرِجُوهُنَّ مِنۢ بُيُوتِهِنَّ وَلَا يَخۡرُجۡنَ إِلَّآ أَن يَأۡتِينَ بِفَٰحِشَةٖ مُّبَيِّنَةٖۚ وَتِلۡكَ حُدُودُ ٱللَّهِۚ
وَمَن يَتَعَدَّ حُدُودَ ٱللَّهِ فَقَدۡ ظَلَمَ نَفۡسَهُۥۚ لَا تَدۡرِي لَعَلَّ ٱللَّهَ يُحۡدِثُ بَعۡدَ ذَٰلِكَ أَمۡرٗا ١

(1) ឱណាពី!នៅពេលពួកអ្នកឬម្នាក់ក្នុងចំណោមប្រជាជាតិអ្នកចង់លែងលះភរិយាចូរ
ពួកអ្នកលែង លះពួកនាងតាមអ៊ីតហ្ទ៍ះរបស់ពួកនាង។ពេលជ្រះស្អាតពីឈាមរដូវនឹង
មិនទាន់បានរួមរ័ក។ហើយចូរពួកអ្នករាប់ពេលវេលានោះផងដើម្បីឱ្យច្បាស់លាស់នៅ
ពេលដែលពួកអ្នកចង់ត្រឡប់ទៅរកពួកនាងវិញ។ហើយចូរពួកអ្នកកោតខ្លាចអល់
ឡោះដែលជាម្ចាស់របស់ពួកអ្នកដោយអនុវត្តតាមអ្វីដែលទ្រង់បញ្ជារនិងបោះបង់អ្វី
ដែលទ្រង់ហាមឃាត់។ចូរពួកអ្នកកុំបណ្តេញពួកនាងដែលត្រូវបានលែងលះចេញពី
លំនៅដ្ឋានរបស់ពួកនាង។ហើយពួកនាងក៏មិនត្រូវចាកចេញដោយចិត្តឯងដែរ។រហូត
ទាល់តែដល់ថេរៈវេលាវាលើកលែងតែពួកនាងប្រព្រឹត្តអំពើអសីលធម៌យ៉ាង
ច្បាស់លាស់ប៉ុណ្ណោះដូចជាហ្ស៊ីណា(ប្រុសស្រីរួមរ័កជាមួយគ្នាដោយមិនបានរៀបការ)
។នោះជាច្បាប់របស់អល់ឡោះដែលបានកំណត់លើមនុស្សលោក។ហើយអ្នកណា
ដែលបំពាននឹងច្បាប់របស់អល់ឡោះគឺគេពិតជាបានបំពានលើខ្លួនឯងដោយពួកគេ
បាននាំមកនូវភាពមហន្តរាយដោយមូលហេតុប្រឆាំងនឹងម្ចាស់របស់គេ។អ្នកមិនដឹង
ឡើយជួនកាលអល់ឡោះអាចធ្វើឱ្យរឿងថ្មីមួយកើតឡើងបន្ទាប់ពីការលែងលះនោះ
ដោយប្តីចង់ត្រឡប់ទៅរកភរិយាវិញ។

فَإِذَا بَلَغۡنَ أَجَلَهُنَّ فَأَمۡسِكُوهُنَّ بِمَعۡرُوفٍ أَوۡ فَارِقُوهُنَّ بِمَعۡرُوفٖ وَأَشۡهِدُواْ ذَوَيۡ عَدۡلٖ
مِّنكُمۡ وَأَقِيمُواْ ٱلشَّهَٰدَةَ لِلَّهِۚ ذَٰلِكُمۡ يُوعَظُ بِهِۦ مَن كَانَ يُؤۡمِنُ بِٱللَّهِ وَٱلۡيَوۡمِ ٱلۡأٓخِرِۚ وَمَن
يَتَّقِ ٱللَّهَ يَجۡعَل لَّهُۥ مَخۡرَجٗا ٢

(2) ហើយនៅពេលដែលពួកនាងជិតផុតពេលកំណត់ការលែងលះចូរពួកអ្នកវិលទៅ
រកពួកនាងវិញក្នុង លក្ខណៈមួយសមរម្យឬឱ្យពួកនាងនៅរហូតអស់អ៊ីតហ្ទ៍ះ។ហើយផ្ត
ល់សិទ្ធិសិរីភាពដល់នាងហើយត្រូវផ្តល់អ្វីៗដែលជាកម្មសិទ្ធិរបស់នាងជូននាង។បើពួក
អ្នកចង់ជាគ្នាឬលែងលះគ្នាជាមួយនឹងពួកនាង ចូរពួកអ្នករកសាក្សីដ៏យុត្តិធម៌ចំនួនពីរ
នាក់នៅក្នុងចំណោមពួកអ្នកដើម្បីបញ្ចប់ជម្លោះ។ហើយចូរធ្វើសក្សីសម្រាប់អល់ឡោះ
ដោយសេចក្តីស្មោះត្រង់។ ប្រការទាំងនោះគឺគេអប់រំចំពោះអ្នកណាដែលមានជំនឿលើ
អល់ឡោះនិងថ្ងៃបរលោកពីព្រោះមានតែអ្នកមានជំនឿមួយគត់ដែលទទួលបានផល
ប្រយោជន៍ពីការទូន្មាននេះ។ហើយអ្នកណាដែល កោតខ្លាចអល់ឡោះដោយអនុវត្ត
តាមបទបញ្ជារនិងជៀសវាងប្រការហាមឃាត់ទ្រង់នឹងផ្តល់ដំណោះស្រាយសម្រាប់គេ
នូវគ្រប់បញ្ហាដែលគេបានជួបប្រទះ។





وَيَرۡزُقۡهُ مِنۡ حَيۡثُ لَا يَحۡتَسِبُۚ وَمَن يَتَوَكَّلۡ عَلَى ٱللَّهِ فَهُوَ حَسۡبُهُۥٓۚ إِنَّ ٱللَّهَ بَٰلِغُ أَمۡرِهِۦۚ
قَدۡ جَعَلَ ٱللَّهُ لِكُلِّ شَيۡءٖ قَدۡرٗا ٣ وَٱلَّٰٓـِٔي يَئِسۡنَ مِنَ ٱلۡمَحِيضِ مِن نِّسَآئِكُمۡ
إِنِ ٱرۡتَبۡتُمۡ فَعِدَّتُهُنَّ ثَلَٰثَةُ أَشۡهُرٖ وَٱلَّٰٓـِٔي لَمۡ يَحِضۡنَۚ وَأُوْلَٰتُ ٱلۡأَحۡمَالِ أَجَلُهُنَّ أَن
يَضَعۡنَ حَمۡلَهُنَّۚ وَمَن يَتَّقِ ٱللَّهَ يَجۡعَل لَّهُۥ مِنۡ أَمۡرِهِۦ يُسۡرٗا ٤ ذَٰلِكَ أَمۡرُ ٱللَّهِ
أَنزَلَهُۥٓ إِلَيۡكُمۡۚ وَمَن يَتَّقِ ٱللَّهَ يُكَفِّرۡ عَنۡهُ سَيِّـَٔاتِهِۦ وَيُعۡظِمۡ لَهُۥٓ أَجۡرًا ٥

3 ហើយទ្រង់ផ្តល់លាភសក្ការៈដល់គេដោយខ្លួនគេនឹកស្មានមិនដល់។ហើយអ្នកណាដែលប្រគល់ការទុកចិត្តលើអល់ឡោះគឺទ្រង់ជាអ្នកផ្តល់ភាពគ្រប់គ្រាន់ដល់គេ។ពិតប្រាកដណាស់អល់ឡោះគឺជាអ្នកសម្រេចនូវរាល់គោលបំណងរបស់ទ្រង់។គ្មានអ្វីដែលទ្រង់មិនអាចធ្វើបានឡើយ។ពិតណាស់អល់ឡោះបានបង្កើតរាល់អ្វីៗទាំងអស់គឺមានកំរិត។រាល់ទុក្ខកង្វល់ទាំងឡាយមានកាលកំណត់របស់វាហើយសេចក្តីសុខក៏មានកាលកំណត់របស់វាដែរ។គ្មានមនុស្សណាម្នាក់ស្ថិតនៅលើមួយក្នុងចំណោមវារហូតនោះទេ។

4 ហើយបណ្តាស្ត្រីដែលអស់ឈាមរដូវដោយសារវ័យចំណាស់ក្នុងចំណោមភរិយារបស់ពួកអ្នកដែលបានលែងលះប្រសិនបើពួកអ្នកសង្ស័យអំពីពេលកំណត់នៃការលែងលះដាច់ស្រឡះនោះគឺពេលកំណត់របស់ពួកនាងចំនួនបីខែ។ហើយចំពោះស្ត្រីដែលមិនទាន់មានឈាមរដូវក៏ដូច្នោះដែរពេលកំណត់របស់ពួកនាងចំនួនបីខែ។រីឯបណ្តាស្ត្រីមានគភ៌វិញពេលកំណត់នៃការលែងលះដាច់ស្រឡះរបស់ពួកនាងគឺរហូតដល់ពួកនាងសម្រាលកូនរួច។ហើយអ្នកណាដែលកោតខ្លាចអល់ឡោះដោយអនុវត្តតាមបទបញ្ជារបស់ទ្រង់និងជៀសវាងការហាមឃាត់របស់ទ្រង់អល់ឡោះនឹងផ្តល់ភាពងាយស្រួលនូវរាល់កិច្ចការនិងទុក្ខលំបាករបស់គេ។

5 រាល់អ្វីដែលបានរៀបរាប់មានដូចជាក្បួនច្បាប់នៃការលែងលះការត្រូវរង់ចាំនិងថេរៈវេលាវាគឺជាបទបញ្ជារបស់អល់ឡោះដែលបានបញ្ចុះវាមកចំពោះពួកអ្នកដើម្បីឱ្យពួកអ្នកអនុវត្តតាមវា។ហើយអ្នកណាដែលកោតខ្លាចអល់ឡោះដោយអនុវត្តតាមបទបញ្ជារបស់ទ្រង់និងជៀសវាងការហាមឃាត់របស់ទ្រង់អល់ឡោះនឹងលុបបំបាត់ពីគេនូវរាល់បាបកម្មទាំងឡាយរបស់គេហើយទ្រង់នឹងប្រទានឱ្យគេវិញនូវផលបុណ្យដ៏ធំធេង។វាគឺឋានសួគ៌និងលាភសក្ការៈដានិរន្ត។

أَسۡكِنُوهُنَّ مِنۡ حَيۡثُ سَكَنتُم مِّن وُجۡدِكُمۡ وَلَا تُضَآرُّوهُنَّ لِتُضَيِّقُواْ عَلَيۡهِنَّۚ وَإِن كُنَّ أُوْلَٰتِ حَمۡلٖ
فَأَنفِقُواْ عَلَيۡهِنَّ حَتَّىٰ يَضَعۡنَ حَمۡلَهُنَّۚ فَإِنۡ أَرۡضَعۡنَ لَكُمۡ فَـَٔاتُوهُنَّ أُجُورَهُنَّ وَأۡتَمِرُواْ بَيۡنَكُم بِمَعۡرُوفٖۖ
وَإِن تَعَاسَرۡتُمۡ فَسَتُرۡضِعُ لَهُۥٓ أُخۡرَىٰ ٦ لِيُنفِقۡ ذُو سَعَةٖ مِّن سَعَتِهِۦۖ وَمَن قُدِرَ عَلَيۡهِ رِزۡقُهُۥ
فَلۡيُنفِقۡ مِمَّآ ءَاتَىٰهُ ٱللَّهُۚ لَا يُكَلِّفُ ٱللَّهُ نَفۡسًا إِلَّا مَآ ءَاتَىٰهَاۚ سَيَجۡعَلُ ٱللَّهُ بَعۡدَ عُسۡرٖ يُسۡرٗا ٧

6 ចូរពួកអ្នកផ្តល់កន្លែងឱ្យពួកនាង( ភរិយាដែលលែងលះមិនទាន់ដាច់ស្រឡះ )នៅទីកន្លែងណាដែលពួកអ្នករស់នៅតាមលទ្ធភាពរបស់ពួកអ្នក។ហើយចូរពួកអ្នកកុំបង្កភាពគ្រោះថ្នាក់ពីការផ្គត់ផ្គង់និងការផ្តល់ទីកន្លែងស្នាក់នៅដល់ពួកនាងជាហេតុធ្វើឱ្យពួកនាងមានការចង្អៀតចិត្តក្នុងការរស់នៅឱ្យសោះ។ហើយប្រសិនបើពួកនាងមានគភ៌ចូរពួកអ្នកបរិច្ចាគឱ្យពួកនាងរហូតទាល់តែពួកនាងសម្រាលកូនរួច។ហើយប្រសិនបើពួកនាងបំបៅកូនឱ្យពួកអ្នកចូរពួកអ្នកផ្តល់ឱ្យពួកនាងនូវថ្លៃឈ្នួលរបស់ពួកនាងហើយចូរប្រឹក្សាគ្នារវាងពួកអ្នកស្វាមីនឹងភរិយាក្នុងវិធីមួយដ៏សមរម្យ។ប្រសិនបើ



អ្នកទាំងពីរមិនឯកភាពគ្នាចូរឱ្យឪពុករកអ្នកបំបៅផ្សេងទៀតមកជំនួស។

7 អ្នកដែលមានទ្រព្យសម្បត្តិច្រើនចូរឱ្យគេបរិច្ចាគឱ្យបានសមរម្យអំពីទ្រព្យសម្បត្តិរបស់គេ។រីឯអ្នកណាដែលទ្រព្យសម្បត្តិរបស់គេមានកំណត់ចូរឱ្យគេបរិច្ចាគទៅតាមអ្វីដែលអល់ឡោះបានផ្តល់ឱ្យគេ។អល់ឡោះពុំដាក់បន្ទុកលើបុគ្គលណាម្នាក់ក្រៅពីអ្វីដែលទ្រង់បានផ្តល់ឱ្យគេឡើយ។អល់ឡោះពុំដាក់បន្ទុកធ្ងន់ធ្ងរលើសសមត្ថភាពគេឡើយ។អល់ឡោះនឹងផ្តល់ឱ្យមានភាពងាយស្រួលវិញបន្ទាប់ពីមានភាពលំបាក។

وَكَأَيِّن مِّن قَرْيَةٍ عَتَتْ عَنْ أَمْرِ رَبِّهَا وَرُسُلِهِۦ فَحَاسَبْنَٰهَا حِسَابًا شَدِيدًا وَعَذَّبْنَٰهَا عَذَابًا نُّكْرًا
٨ فَذَاقَتْ وَبَالَ أَمْرِهَا وَكَانَ عَٰقِبَةُ أَمْرِهَا خُسْرًا ٩ أَعَدَّ ٱللَّهُ لَهُمْ عَذَابًا شَدِيدًا ۖ فَٱتَّقُوا۟ ٱللَّهَ
يَٰٓأُو۟لِى ٱلْأَلْبَٰبِ ٱلَّذِينَ ءَامَنُوا۟ ۚ قَدْ أَنزَلَ ٱللَّهُ إِلَيْكُمْ ذِكْرًا ١٠ رَّسُولًا يَتْلُوا۟ عَلَيْكُمْ ءَايَٰتِ ٱللَّهِ مُبَيِّنَٰتٍ
لِّيُخْرِجَ ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ مِنَ ٱلظُّلُمَٰتِ إِلَى ٱلنُّورِ ۚ وَمَن يُؤْمِنۢ بِٱللَّهِ وَيَعْمَلْ صَٰلِحًا
يُدْخِلْهُ جَنَّٰتٍ تَجْرِى مِن تَحْتِهَا ٱلْأَنْهَٰرُ خَٰلِدِينَ فِيهَآ أَبَدًا ۖ قَدْ أَحْسَنَ ٱللَّهُ لَهُۥ رِزْقًا ١١

8 ហើយមានអ្នកភូមិស្រុកជាច្រើនបានប្រឆាំងនឹងបទបញ្ជានៃម្ចាស់របស់ពួកគេនិងបណ្តាអ្នកនាំសាររបស់ទ្រង់។ហើយយើងបានទូទាត់ពួកគេនូវការទូទាត់មួយដ៏តឹងរ៉ឹងបំផុតដោយសារទង្វើអាក្រក់របស់គេ។ហើយយើងបានធ្វើទារុណកម្មពួកគេនូវទារុណកម្មមួយដ៏សែនវេទនាបំផុតនៅលើលោកិយនិងថ្ងៃបរលោក។

9 ហើយពួកគេបានភ្លក្សនូវលទ្ធផលអាក្រក់នៃទង្វើរបស់ពួកគេ។ហើយលទ្ធផលចុងក្រោយនៃទង្វើរបស់ពួកគេគឺការខាតបង់ទាំងនៅលើលោកិយនិងថ្ងៃបរលោក។

10 អល់ឡោះបានរៀបចំឱ្យពួកគេនូវទារុណកម្មដ៏ធ្ងន់ធ្ងរបំផុត។ដូច្នេះចូរពួកអ្នកកោតខ្លាចអល់ឡោះឱបណ្តាបញ្ញាជនដែលមានជំនឿចំពោះអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់!ដោយអនុវត្តតាមបទបញ្ជារបស់ទ្រង់និងជៀសវាងការហាមឃាត់របស់ទ្រង់ជាការពិតណាស់អល់ឡោះបានបញ្ចុះការរំលឹកមួយ(គម្ពីរគួរអាន)មកចំពោះពួកអ្នកដើម្បីរំលឹកពួកអ្នកពីលទ្ធផលដ៏អាក្រក់នៃការប្រឆាំងនិងលទ្ធផលដ៏ល្អប្រសើរនៃការអនុវត្តតាម។

11 អល់ឡោះបានបញ្ជូនអ្នកនាំសារម្នាក់(មូហាំម៉ាត់) ដើម្បីសូត្រអាយ៉ាត់ៗរបស់អល់ឡោះដ៏ច្បាស់លាស់។ដើម្បីឱ្យបណ្តាអ្នកដែលមានជំនឿចំពោះអល់ឡោះនិងអ្នកនាំសារនិងបានសាងអំពើល្អត្រឹមត្រូវចាកចេញពីភាពងងឹត(គ្មានជំនឿ)ទៅកាន់ភាពមានពន្លឺ(មានជំនឿ)។ហើយអ្នកណាដែលមានជំនឿលើអល់ឡោះនិងបានសាងអំពើល្អត្រឹមត្រូវនោះទ្រង់នឹងបញ្ចូលគេទៅក្នុងឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវាដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ។ជាការពិតណាស់អល់ឡោះបានផ្តល់លាភសក្ការៈដ៏ប្រសើរបំផុតដល់គេដោយបញ្ចូលគេទៅក្នុងឋានសួគ៌ជាអមតៈ។

ٱللَّهُ ٱلَّذِى خَلَقَ سَبْعَ سَمَٰوَٰتٍ وَمِنَ ٱلْأَرْضِ مِثْلَهُنَّ يَتَنَزَّلُ ٱلْأَمْرُ بَيْنَهُنَّ لِتَعْلَمُوٓا۟ أَنَّ ٱللَّهَ
عَلَىٰ كُلِّ شَىْءٍ قَدِيرٌ وَأَنَّ ٱللَّهَ قَدْ أَحَاطَ بِكُلِّ شَىْءٍ عِلْمًۢا

12 អល់ឡោះជាអ្នកដែលបានបង្កើតមេឃទាំងប្រាំពីរជាន់និងផែនដីក៏ដូចគ្នាដែរ។បទបញ្ជារបស់អល់ឡោះត្រូវគេបញ្ចុះមករវាងវាទាំងពីរ(មេឃនិងផែនដី)។ដើម្បីឱ្យពួកអ្នកដឹងថាពិតប្រាកដណាស់អល់ឡោះមានអានុភាពលើអ្វីៗទាំងអស់ហើយពិតប្រាកដណាស់អល់ឡោះដឹងជ្រួតជ្រាបលើអ្វីៗទាំងអស់។





# អាត់តះរីម

**គោលបំណងនៃស៊ូរោះ**

ការអប់រំនៅក្នុងផ្ទះណាពីដើម្បីជាគំរូដ៏ល្អប្រពៃដល់ក្រុមគ្រួសារនិងសង្គម។

**តាហ្សៀរ**

يَٰٓأَيُّهَا ٱلنَّبِيُّ لِمَ تُحَرِّمُ مَآ أَحَلَّ ٱللَّهُ لَكَۖ تَبۡتَغِي مَرۡضَاتَ أَزۡوَٰجِكَۚ وَٱللَّهُ غَفُورٞ رَّحِيمٞ ١ قَدۡ
فَرَضَ ٱللَّهُ لَكُمۡ تَحِلَّةَ أَيۡمَٰنِكُمۡۚ وَٱللَّهُ مَوۡلَىٰكُمۡۖ وَهُوَ ٱلۡعَلِيمُ ٱلۡحَكِيمُ ٢ وَإِذۡ أَسَرَّ ٱلنَّبِيُّ إِلَىٰ
بَعۡضِ أَزۡوَٰجِهِۦ حَدِيثٗا فَلَمَّا نَبَّأَتۡ بِهِۦ وَأَظۡهَرَهُ ٱللَّهُ عَلَيۡهِ عَرَّفَ بَعۡضَهُۥ وَأَعۡرَضَ عَنۢ بَعۡضٖۖ
فَلَمَّا نَبَّأَهَا بِهِۦ قَالَتۡ مَنۡ أَنۢبَأَكَ هَٰذَاۖ قَالَ نَبَّأَنِيَ ٱلۡعَلِيمُ ٱلۡخَبِيرُ ٣ إِن تَتُوبَآ إِلَى ٱللَّهِ
فَقَدۡ صَغَتۡ قُلُوبُكُمَاۖ وَإِن تَظَٰهَرَا عَلَيۡهِ فَإِنَّ ٱللَّهَ هُوَ مَوۡلَىٰهُ وَجِبۡرِيلُ وَصَٰلِحُ
ٱلۡمُؤۡمِنِينَۖ وَٱلۡمَلَٰٓئِكَةُ بَعۡدَ ذَٰلِكَ ظَهِيرٌ ٤ عَسَىٰ رَبُّهُۥٓ إِن طَلَّقَكُنَّ أَن يُبۡدِلَهُۥٓ أَزۡوَٰجًا
خَيۡرٗا مِّنكُنَّ مُسۡلِمَٰتٖ مُّؤۡمِنَٰتٖ قَٰنِتَٰتٖ تَٰٓئِبَٰتٍ عَٰبِدَٰتٖ سَٰٓئِحَٰتٖ ثَيِّبَٰتٖ وَأَبۡكَارٗا ٥

(1) ឱណាពី!ហេតុអ្វីបានជាអ្នកហាមឃាត់ខ្លួនឯងនូវអ្វីដែលអល់ឡោះអនុញ្ញាតឱ្យអ្នកពីការរួមដំណេកជាមួយភរិយារបស់គាត់ម៉ារីយ៉ះខណៈដែលអ្នកចង់បានការពេញចិត្តនៃភរិយាៗរបស់អ្នកដោយការហាមខ្លួនឯងពីចំណីហាឡាលនោះ?អល់ឡោះជាម្ចាស់មហាអភ័យទោសមហាអាណិតមេត្តាចំពោះអ្វីដែលអ្នកបានធ្វេសប្រហែស។

(2) ជាការពិតណាស់អល់ឡោះបានដាក់កាតព្វកិច្ចចំពោះពួកអ្នកក្នុងការដោះស្រាយនៃពាក្យសម្បថរបស់ពួកអ្នកដោយការផាកពិន័យប្រសិនបើអ្នកយល់ឃើញថាវាជាប្រការល្អវិញនោះ។អល់ឡោះគឺជាអ្នកគាំពារពួកអ្នកអល់ឡោះទ្រង់មហាដឹងនូវអ្វីមានសារប្រយោជន៍និងប្រសើរសម្រាប់ពួកអ្នក។ទ្រង់ប្រកបដោយគតិបណ្ឌិតទាំងទង្វើនិងពាក្យសម្តីរបស់ទ្រង់។

(3) ហើយចូរចងចាំនៅពេលដែលណាពីបានប្រាប់រឿងសម្ងាត់មួយដល់ភរិយារបស់គាត់ហាហ្វសោះ។ហើយក្នុងចំណោមរឿងទាំងនោះគឺមានរឿងដែលណាពីនឹងមិនទៅរួមដំណេកជាមួយភរិយារបស់គាត់ម៉ារីយ៉ះឡើយ។ហើយនៅពេលដែលនាងបានប្រាប់រឿងរ៉ាវនោះដល់អាអ៊ីស្ហះពេលនោះអល់ឡោះបានលាតត្រដាងរឿងនោះឱ្យណាពីដឹង។គាត់ក៏បានប្រាប់ហាហ្វស្វោះឱ្យដឹងនូវរឿងមួយចំនួននិងលាក់មួយចំនួន។ហើយនៅពេលដែលគាត់បានប្រាប់រឿងទាំងនោះដល់នាង។នាងបានសួរថាៈតើអ្នកណាប្រាប់រឿងនេះដល់អ្នក។គាត់ក៏បានឆ្លើយថាៈគឺម្ចាស់ដែលមហាដឹងជ្រួតជ្រាបបានប្រាប់ខ្ញុំ។

(4) ប្រសិនបើអ្នកទាំងពីរ(អាអ៊ីស្ហះនឹងហាហ្វសោះ)សារភាពទោសកំហុសចំពោះអល់ឡោះទ្រង់នឹងអភ័យទោសដល់អ្នកទាំងពីរជាមិនខានព្រោះជាការពិតណាស់ដួងចិត្តរបស់អ្នកទាំងពីរបានទោរទន់ទៅរកអ្វីដែលណាពីមិនចូលចិត្ត។តែប្រសិនបើអ្នកទាំងពីរជួយគ្នាប្រឆាំងនឹងគាត់(មូហាំម៉ាត់)វិញនោះគាត់នឹងមានអ្នកជួយ។ពិតប្រាកដណាស់អល់ឡោះជាអ្នកគាំពារគាត់ហើយជីព្រីលនិងអ្នកដែលសាងអំពើល្អត្រឹមត្រូវនៃបណ្តាអ្នកមានជំនឿព្រមទាំងម៉ាឡាអ៊ីកាត់ក៏ជាអ្នកជួយគាត់ក្រោយពីនោះដែរ។

(5) ប្រសិនបើគាត់លែងលះពួកអ្នកសង្ឃឹមថាម្ចាស់របស់គាត់នឹងផ្លាស់ប្តូរឱ្យគាត់នូវភរិយាជាច្រើនផ្សេងទៀតដែលជាស្ត្រីមូស្លីមមានជំនឿអនុវត្តតាមកាតព្វកិច្ចដ៏ស្វាមមានជំនឿងនឹងអល់ឡោះជាស្ត្រីដែលគោរពប្រតិបត្តិចំពោះអល់ឡោះនិងរ៉សូលុលឡោះរបស់ទ្រង់ជាអ្នកសារភាពកំហុសពីបាបកម្មឱនលំទោនចំពោះអល់ឡោះជាអ្នកកាន់



អំណាត់បួសដែលពួកនាងមួយចំនួនជាស្រីមេម៉ាយនិងមួយចំនួនទៀតជាស្រីក្រមុំល្អ
ជាងពួកអ្នកទៅទៀត។

يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ قُوٓا۟ أَنفُسَكُمْ وَأَهْلِيكُمْ نَارًا وَقُودُهَا ٱلنَّاسُ وَٱلْحِجَارَةُ عَلَيْهَا مَلَٰٓئِكَةٌ
غِلَاظٌ شِدَادٌ لَّا يَعْصُونَ ٱللَّهَ مَآ أَمَرَهُمْ وَيَفْعَلُونَ مَا يُؤْمَرُونَ ٦ يَٰٓأَيُّهَا ٱلَّذِينَ كَفَرُوا۟ لَا
تَعْتَذِرُوا۟ ٱلْيَوْمَ إِنَّمَا تُجْزَوْنَ مَا كُنتُمْ تَعْمَلُونَ ٧ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ تُوبُوٓا۟ إِلَى ٱللَّهِ
تَوْبَةً نَّصُوحًا عَسَىٰ رَبُّكُمْ أَن يُكَفِّرَ عَنكُمْ سَيِّـَٔاتِكُمْ وَيُدْخِلَكُمْ جَنَّٰتٍ تَجْرِى مِن
تَحْتِهَا ٱلْأَنْهَٰرُ يَوْمَ لَا يُخْزِى ٱللَّهُ ٱلنَّبِىَّ وَٱلَّذِينَ ءَامَنُوا۟ مَعَهُۥ نُورُهُمْ يَسْعَىٰ بَيْنَ أَيْدِيهِمْ
وَبِأَيْمَٰنِهِمْ يَقُولُونَ رَبَّنَآ أَتْمِمْ لَنَا نُورَنَا وَٱغْفِرْ لَنَآ إِنَّكَ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ٨

6 ឱបណ្តាអ្នកដែលមានជំនឿ!ចូរពួកអ្នកថែរក្សាខ្លួនប្រាណរបស់ពួកអ្នកនិងក្រុម
គ្រួសាររបស់ពួកអ្នកឱ្យផុតពីភ្លើងនរកដែលវត្ថុសម្រាប់ដុតវានោះគឺមនុស្សនិងដុំថ្ម។
នៅពីលើវាមានម៉ាឡាអ៊ីកាត់ដែលមានទឹកមុខម៉ឺងម៉ាត់ពួកគេមិនល្មើសនឹងបទបញ្ជា
របស់អល់ឡោះនូវអ្វីដែលទ្រង់បានបញ្ជាដល់ពួកគេឡើយហើយពួកគេបំពេញភារ
កិច្ចតាមអ្វីដែលគេបង្គាប់ប្រើចំពោះពួកគេ។ដោយគ្មានការពន្យារពេល។ពួកគេមាន
សមត្ថភាពគ្មានអ្វីបង្អាក់ដំណើរពួកគេនោះទេ។
7 ហើយគេបាននិយាយទៅកាន់ពួកដែលគ្មានជំនឿថាឱពួកដែលគ្មានជំនឿនឹងអ
ល់ឡោះ!ពួកអ្នកមិនចាំបាច់ដោះសារទេនៅថ្ងៃនេះ។ពិតប្រាកដណាស់ពួកអ្នកត្រូវ
បានគេតបស្នងឱ្យនូវអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្ត។
8 ឱបណ្តាអ្នកដែលមានជំនឿ!ចូរពួកអ្នកសារភាពទោសកំហុសចំពោះអល់ឡោះនូវ
ការសារភាពមួយដ៏ស្មោះស្ម័គ្រ។សង្ឃឹមថាម្ចាស់របស់ពួកអ្នកនឹងលុបបំបាត់នូវបាបកម្ម
ទាំងឡាយរបស់ពួកអ្នកហើយទ្រង់នឹងបញ្ចូលពួកអ្នកទៅក្នុងឋានសួគ៌ដែលមានទន្លេជា
ច្រើនហូរពីក្រោមវានៅថ្ងៃគីយ៉ាម៉ាត់។នៅថ្ងៃដែលអល់ឡោះនឹងមិនធ្វើឱ្យណាពីនិង
បណ្តាអ្នកដែលរួមជំនឿជាមួយគាត់អាម៉ាស់ដោយឱ្យពួកគេចូលឋាននរកឡើយ។ពន្លឺ
របស់ពួកគេភ្លឺចែងចាំងនៅខាងមុខនិងនៅខាងស្តាំរបស់ពួកគេនៅពេលឆ្លងស្ពានស៊ីរ៉ត
ដោយពួកគេបួងសួងសុំថាៈឱម្ចាស់របស់ពួកយើង!សូមទ្រង់មេត្តាបំពេញពន្លឺរបស់ពួក
យើងឱ្យនៅភ្លឺចែងចាំងរហូតដល់ពួកយើងបានចូលឋានសួគ៌កុំឱ្យដូចពួកម៉ូណាហ្វិគីន
ដែលពន្លត់ភ្លើងរបស់ពួកគេនៅលើស្ពានស៊ីរ៉ត្តហើយសូមទ្រង់អភ័យទោសឱ្យពួកយើង
ផងពិតប្រាកដណាស់ទ្រង់មានអានុភាពលើអ្វីៗទាំងអស់។

يَٰٓأَيُّهَا ٱلنَّبِىُّ جَٰهِدِ ٱلْكُفَّارَ وَٱلْمُنَٰفِقِينَ وَٱغْلُظْ عَلَيْهِمْ ۚ وَمَأْوَىٰهُمْ جَهَنَّمُ ۖ وَبِئْسَ
ٱلْمَصِيرُ ٩ ضَرَبَ ٱللَّهُ مَثَلًا لِّلَّذِينَ كَفَرُوا۟ ٱمْرَأَتَ نُوحٍ وَٱمْرَأَتَ لُوطٍ ۖ كَانَتَا
تَحْتَ عَبْدَيْنِ مِنْ عِبَادِنَا صَٰلِحَيْنِ فَخَانَتَاهُمَا فَلَمْ يُغْنِيَا عَنْهُمَا مِنَ ٱللَّهِ شَيْـًٔا
وَقِيلَ ٱدْخُلَا ٱلنَّارَ مَعَ ٱلدَّٰخِلِينَ ١٠

9 ឱណាពី(ម៉ូហាំម៉ាត់)!ចូរអ្នកតស៊ូប្រឆាំងនឹងពួកគ្មានជំនឿដោយផ្ទៃដាវនិងពួក
ពុតត្បុតដោយសំដីនិងអនុវត្តច្បាប់ព្រហ្មទណ្ឌហើយត្រូវធ្វើឱ្យបានតឹងរ៉ឹងបំផុតចំពោះ
ពួកគេ។ហើយទីកន្លែងរបស់ពួកគេគឺនរកជើហាន់ណាំដែលជាកន្លែងវិលត្រឡប់ដ៏
អាក្រក់បំផុតនៅថ្ងៃគីយ៉ាម៉ាត់។
10 អល់ឡោះបានលើកយកឧទាហរណ៍សម្រាប់ពួកដែលគ្មានជំនឿចំពោះអល់ឡោះនិង





រ៉សូលលលទ្បោះអំពីភរិយាពីរនាក់របស់អ្នកនាំសាររបស់អល់ទ្បោះគឺណាពីនូហនិងណាពីលូត។ពិតណាស់នាងទាំងពីរជាភរិយានៃខ្ញុំទាំងពីររបស់យើងក្នុងចំណោមខ្ញុំរបស់យើងដែលល្អត្រឹមត្រូវ។តែនាងទាំងពីរបានក្បត់នឹងគេទាំងពីរបានរារាំងគេពីមាគ៌ា របស់អល់ទ្បោះនិងជួយជ្រុំជ្រែកពួកដែលប្រឆាំងទៀត។ហើយគេទាំងពីរ(នូហនិងលូត)មិនអាចជួយអ្វីដល់នាងទាំងពីរឱ្យរួចផុតពីទារុណកម្មអល់ទ្បោះឡើយ។ហើយមានគេនិយាយថា:ចូរអ្នកទាំងពីរចូលទៅក្នុងនរកជាមួយនឹងពួកអ្នកដែលនៅក្នុងនោះចុះ។

وَضَرَبَ ٱللَّهُ مَثَلًا لِّلَّذِينَ ءَامَنُوا۟ ٱمْرَأَتَ فِرْعَوْنَ إِذْ قَالَتْ رَبِّ ٱبْنِ لِى عِندَكَ
بَيْتًا فِى ٱلْجَنَّةِ وَنَجِّنِى مِن فِرْعَوْنَ وَعَمَلِهِۦ وَنَجِّنِى مِنَ ٱلْقَوْمِ ٱلظَّٰلِمِينَ ١١
وَمَرْيَمَ ٱبْنَتَ عِمْرَٰنَ ٱلَّتِىٓ أَحْصَنَتْ فَرْجَهَا فَنَفَخْنَا فِيهِ مِن رُّوحِنَا وَصَدَّقَتْ
بِكَلِمَٰتِ رَبِّهَا وَكُتُبِهِۦ وَكَانَتْ مِنَ ٱلْقَٰنِتِينَ

11 អល់ទ្បោះបានលើកឧទាហរណ៍ពីប្រពន្ធរបស់ហ្វៀរអ៊ូនសម្រាប់ពួកអ្នកដែលមានជំនឿចំពោះអល់ទ្បោះនិងរ៉សូលលុលទ្បោះថាក្បីស្ថិតនៅក្រោមការគ្រប់គ្រងរបស់អ្នកគ្មានជំនឿគឺមិនបង្កគ្រោះថ្នាក់ដល់ពួកគេឡើយដរាបណាពួកគេស្ថិតលើមាគ៌ាត្រឹមត្រូវដូចជាប្រពន្ធរបស់ហ្វៀរអ៊ូននៅពេលដែលនាងបានបួងសួងសុំថា:ឱម្ចាស់របស់ខ្ញុំ!សូមទ្រង់មេត្តាសង់លំនៅដ្ឋានមួយឱ្យខ្ញុំនៅក្បែរទ្រង់នៅក្នុងឋានសួគ៌ផងហើយសូមទ្រង់មេត្តាសង្គ្រោះខ្ញុំឱ្យផុតពីហ្វៀរអោននិងទង្វើរបស់គេហើយនិងមេត្តាសង្គ្រោះខ្ញុំឱ្យរួចផុតពីក្រុមដែលបំពានផង។

12 អល់ទ្បោះក៏បានលើកយកមកធ្វើជាឧទាហរណ៍សម្រាប់បណ្ដាអ្នកដែលមានជំនឿចំពោះអល់ទ្បោះនិងរ៉សូលលុលទ្បោះផងដែរគឺម៉ារយ៉ាំកូនស្រីរបស់អ៊ីមរ៉ននាងបានរក្សាព្រហ្មចារីយ៍របស់នាងជៀសវាងពីអំពើបាយមុខ។ហើយយើងបានប្រើឱ្យជីព្រីលផ្លុំវិញ្ញាណចូលទៅក្នុងស្បូនរបស់នាង។ហើយនាងក៏មានផ្ទៃពោះអ៊ីសាកូនម៉ារយ៉ាំដែលគ្មានឪពុក។ហើយនាងបានជឿនូវពាក្យពេចន៍ទាំងឡាយនៃម្ចាស់របស់នាងនឹងបណ្ដាគម្ពីររបស់ទ្រង់។ហើយនាងគឺជាអ្នកដែលបានស្ថិតក្នុងចំណោមអ្នកដែលប្រតិបត្តិតាមអល់ទ្បោះដោយអនុវត្តតាមបទបញ្ជារបស់ទ្រង់និងជៀសវាងប្រការដែលទ្រង់ហាមឃាត់។

# អាល់មុលក៍

**គោលបំណងនៃស៊ូរ៉ោះ**

-បង្ហាញពីភាពជាម្ចាស់យ៉ាងពេញលេញនិងមាន អនុភាពយ៉ាងខ្លាំងក្លារបស់អល់ទ្បោះដើម្បីឱ្យកោតខ្លាចទៅចំពោះទ្រង់និងប្រុងប្រយ័ត្ននឹងទារុណកម្មរបស់ទ្រង់។

**តាហ្វសៀរ**

تَبَٰرَكَ ٱلَّذِى بِيَدِهِ ٱلْمُلْكُ وَهُوَ عَلَىٰ كُلِّ شَىْءٍ قَدِيرٌ ١
ٱلَّذِى خَلَقَ ٱلْمَوْتَ وَٱلْحَيَوٰةَ لِيَبْلُوَكُمْ أَيُّكُمْ أَحْسَنُ عَمَلًا وَهُوَ ٱلْعَزِيزُ ٱلْغَفُورُ ٢
ٱلَّذِى خَلَقَ سَبْعَ سَمَٰوَٰتٍ طِبَاقًا مَّا تَرَىٰ فِى خَلْقِ ٱلرَّحْمَٰنِ مِن تَفَٰوُتٍ فَٱرْجِعِ ٱلْبَصَرَ هَلْ تَرَىٰ
مِن فُطُورٍ ٣ ثُمَّ ٱرْجِعِ ٱلْبَصَرَ كَرَّتَيْنِ يَنقَلِبْ إِلَيْكَ ٱلْبَصَرُ خَاسِئًا وَهُوَ حَسِيرٌ ٤
وَلَقَدْ زَيَّنَّا ٱلسَّمَآءَ ٱلدُّنْيَا بِمَصَٰبِيحَ وَجَعَلْنَٰهَا رُجُومًا لِّلشَّيَٰطِينِ وَأَعْتَدْنَا لَهُمْ عَذَابَ ٱلسَّعِيرِ

1 សេចក្ដីល្អរបស់អល់ទ្បោះមានច្រើននិងមហាឧត្ដុង្គឧត្ដមជាម្ចាស់ដែលមាន





អំណាចគ្រប់យ៉ាងនៅក្នុងកណ្ដាប់ដៃរបស់ទ្រង់។ហើយទ្រង់មានអានុភាពលើអ្វីៗ
ទាំងអស់។គ្មានអ្វីម្យ៉ាងដែលទ្រង់មិនអាចធ្វើបានឡើយ។

2 ទ្រង់បានបង្កើតសេចក្ដីស្លាប់និងការរស់ដើម្បីសាកល្បងពួកអ្នក(មនុស្សលោក)
តើអ្នកណាមួយក្នុងចំណោមពួកអ្នកដែលបានសាងអំពើល្អជាងគេ។ហើយទ្រង់មហា
ខ្លាំងពូកែគ្មាននរណាម្នាក់ខ្លាំងជាងទ្រង់ឡើយហើយទ្រង់មហាអភ័យទោសនូវ
បាបកម្មសម្រាប់ខ្ញុំបំរើណាណាដែលទទួលសារភាពកំហុស។

3 ទ្រង់បានបង្កើតមេឃប្រាំពីរជាន់ដំរៀបពីលើគ្នាមួយជាន់លើមួយជាន់ដោយមិន
ជាប់គ្នាឡើយ។អ្នកនឹងមិនឃើញការបង្កើតរបស់ព្រះជាម្ចាស់មានភាពឆ្គាំឆ្គងមិនរៀបរយ
មិនខ្ទើងគ្នាតែវាមានផ្ទៃស្មើគ្នាសុក្រឹតឥតខ្ចោះ។ចូរសម្លឹងមើលទៅលើមេឃម្ដងទៀត
ហើយពិចារណាមើលតើផ្ទៃមេឃដ៏ធំទូលំទូលាយនេះមានស្នាមប្រេះស្រាំដែរឬទេ។អ្នក
នឹងមិនឃើញឡើយ។ប៉ុន្តែអ្នកនឹងឃើញការបង្កើតដ៏សុក្រឹតបំផុត។

4 បន្ទាប់មកចូរអ្នកក្រឡេកមើលម្ដងហើយម្ដងទៀតចុះការមើលឃើញនោះនឹងវិល
ត្រឡប់មកកាន់អ្នកវិញក្នុងសភាពអាម៉ាស់ដោយមិនមើលឃើញមានភាពខ្វះខាតអ្វី
ឡើយៗនេះទុកបង្ហាញភស្តុតាងដ៏សុក្រឹតបំផុតនិងគ្មានលេសអ្វីតវ៉ា។

5 ហើយជាការពិតណាស់យើងបានតុបតែងលំអមេឃជាន់ក្រោមដោយហ្វូងតារា
ជាច្រើនបំភ្លឺលោកីយ៍។ហើយយើងបានបង្កើតហ្វូងតារាដើម្បីបណ្ដេញពួកស្ហ៊ីតន
ដែលមកលួចស្ដាប់ហើយយើងបានរៀបចំសម្រាប់ពួកវានូវទារុណកម្មនៃភ្លើងនរក
ដែលឆេះសន្ធោសន្ធៅ។

وَلِلَّذِينَ كَفَرُوا۟ بِرَبِّهِمْ عَذَابُ جَهَنَّمَ ۖ وَبِئْسَ ٱلْمَصِيرُ ٦ إِذَآ أُلْقُوا۟ فِيهَا سَمِعُوا۟ لَهَا شَهِيقًا
وَهِىَ تَفُورُ ٧ تَكَادُ تَمَيَّزُ مِنَ ٱلْغَيْظِ ۖ كُلَّمَآ أُلْقِىَ فِيهَا فَوْجٌ سَأَلَهُمْ خَزَنَتُهَآ أَلَمْ يَأْتِكُمْ نَذِيرٌ ٨
قَالُوا۟ بَلَىٰ قَدْ جَآءَنَا نَذِيرٌ فَكَذَّبْنَا وَقُلْنَا مَا نَزَّلَ ٱللَّهُ مِن شَىْءٍ إِنْ أَنتُمْ إِلَّا فِى ضَلَٰلٍ كَبِيرٍ ٩
وَقَالُوا۟ لَوْ كُنَّا نَسْمَعُ أَوْ نَعْقِلُ مَا كُنَّا فِىٓ أَصْحَٰبِ ٱلسَّعِيرِ ١٠
فَٱعْتَرَفُوا۟ بِذَنۢبِهِمْ فَسُحْقًا لِّأَصْحَٰبِ ٱلسَّعِيرِ ١١

6 ហើយសម្រាប់ពួកដែលប្រឆាំងនឹងម្ចាស់របស់ពួកគេគឺនៅថ្ងៃគីយ៉ាម៉ាត់ពួកគេនឹង
ទទួលទារុណកម្មនៃភ្លើងនរកជើហាន់ណាំដែលជាកន្លែងវិលត្រឡប់ដ៏អាក្រក់បំផុត។

7 នៅពេលដែលពួកគេត្រូវបានគេគ្រវែងចូលទៅក្នុងភ្លើងនរកពួកគេបានឮសម្រែកដ៏
អាក្រក់យ៉ាងខ្លាំងក្លាខណៈដែលវាកំពុងតែពុះកញ្ជ្រោលដូចទឹកពុះក្នុងឆ្នាំង។

8 វាស្ទើរតែបែកខ្ចាត់ខ្ចាយដោយសារកំហឹងដ៏ខ្លាំងក្លារបស់វាលើអ្នកដែលបានចូល
ក្នុងវា។រាល់ពេលដែលក្រុមមួយត្រូវបានគេគ្រវែងចូលទៅក្នុងវាអ្នកយាមរបស់វាបាន
សួរទៅពួកគេថាៈតើកាលនៅលោកីយ៍អត់មានរ៉ស៊ូលុលឡោះមកដាស់តឿនពួកអ្នក
ឱ្យប្រុងប្រយ័ត្នពីទារុណកម្មរបស់អល់ឡោះទេឬ ?

9 ពួកគេឆ្លើយថាៈពិតណាស់មានរ៉ស៊ូលុលឡោះមកដាស់តឿនពួកយើងឱ្យប្រុង
ប្រយ័ត្នពីទារុណកម្មរបស់អល់ឡោះប៉ុន្តែពួកយើងបានបដិសេធ។ហើយពួកយើង
បាននិយាយថាៈអល់ឡោះមិនបានបញ្ចុះ អ្វីបន្តិចមកឡើយៗពួកអ្នក(អ្នកនាំសារ)
គ្មានអ្វីក្រៅពីស្ថិតក្នុងភាពវង្វេងដ៏សែនឆ្ងាយអំពីការពិតនោះឡើយ។

10 ពួកគេនិយាយទៀតថាបើសិនជាពួកយើងព្រមស្ដាប់ដោយការត្រិះរិះពិចារណាឬ
ពួកយើងប្រើបញ្ញាបែងចែកនិងពិចារណានោះពួកយើងក៏មិនធ្លាក់ខ្លួនក្នុងចំណោមពួក
អ្នកចុះនរកដែរ។បើសិនជាយើងជឿចំពោះរ៉ស៊ូលុលឡោះហើយជឿនូវអ្វីដែលគេបាន




នាំមកនោះយើងនិងឋិតក្នុងចំណោមអ្នកដែលបានចូលឋានសួគ៌។
(11) ពួកគេទទួលស្គាល់កំហុសរបស់ខ្លួនជាកំហុសដែលសក្តិសមនឹងទទួលទារុណកម្មភ្លើងនរក។ដូច្នេះការឃ្លាតឆ្ងាយពីក្តីមេត្តាករុណារបស់អល់ឡោះនោះគឺសម្រាប់ពួកឋាននរក។

**បន្ទាប់ពីអល់ឡោះបានរៀបរាប់ពីស្ថានភាពនិងលទ្ធផលចុងក្រោយរបស់ពួកអ្នកប្រឆាំងហើយនោះអល់ឡោះក៏ចាប់ផ្តើមរៀបរាប់ពីអ្នកដែលមានជំនឿនិងរង្វាន់របស់គេផងដែរ។**

إِنَّ ٱلَّذِينَ يَخۡشَوۡنَ رَبَّهُم بِٱلۡغَيۡبِ لَهُم مَّغۡفِرَةٞ وَأَجۡرٞ كَبِيرٞ ﴿١٢﴾ وَأَسِرُّواْ قَوۡلَكُمۡ أَوِ ٱجۡهَرُواْ
بِهِۦٓۖ إِنَّهُۥ عَلِيمُۢ بِذَاتِ ٱلصُّدُورِ ﴿١٣﴾ أَلَا يَعۡلَمُ مَنۡ خَلَقَ وَهُوَ ٱللَّطِيفُ ٱلۡخَبِيرُ ﴿١٤﴾
هُوَ ٱلَّذِي جَعَلَ لَكُمُ ٱلۡأَرۡضَ ذَلُولٗا فَٱمۡشُواْ فِي مَنَاكِبِهَا وَكُلُواْ مِن رِّزۡقِهِۦۖ وَإِلَيۡهِ ٱلنُّشُورُ ﴿١٥﴾

(12) ពិតប្រាកដណាស់បណ្តាអ្នកដែលកោតខ្លាចម្ចាស់របស់ពួកគេដោយអាថ៌កំបាំងពួកគេនឹងទទួលបាននូវការអភ័យទោសនូវរាល់បាបកម្មហើយពួកគេនឹងទទួលបានផលបុណ្យដ៏ធំធេងគឺឋានសួគ៌។
(13) ទោះជាពួកគេលាក់បាំងសំដីរបស់ពួកគេឬបើកចំហអល់ឡោះមហាដឹង។ពិតណាស់ទ្រង់ដឹងនូវអ្វីដែលលាក់នៅក្នុងទ្រូង។គ្មានអ្វីលាក់បាំងនឹងទ្រង់ឡើយ។
(14) តើអ្នកដែលបានបង្កើតអាថ៌កំបាំងនិងរឿងលាក់ទុកក្នុងចិត្តទ្រង់មិនដឹងពីវាទេឬ?ទ្រង់មហាដឹងល្អិតល្អន់ពីអ្វីដែលនៅក្នុងចិត្តទ្រង់ដឹងច្បាស់នូវរឿងលាក់បាំងទាំងឡាយ។គ្មានអ្វីមួយអាចលាក់បាំងចំពោះទ្រង់បានឡើយ។
(15) ទ្រង់ជាអ្នកដែលបានបង្កើតផែនដីឱ្យមានភាពងាយស្រួលសម្រាប់ពួកអ្នក។ដូច្នេះចូរពួកអ្នកធ្វើដំណើរគ្រប់ទិសទីនៅលើវាហើយចូរទទួលទានចុះនូវល្បាភសក្ការៈដែលទ្រង់បានប្រទានឱ្យពួកអ្នក។ហើយការរស់ឡើងវិញដើម្បីជំនុំជំរះគឺឆ្ពោះទៅរកទ្រង់តែមួយគត់។

ءَأَمِنتُم مَّن فِي ٱلسَّمَآءِ أَن يَخۡسِفَ بِكُمُ ٱلۡأَرۡضَ فَإِذَا هِيَ تَمُورُ ﴿١٦﴾
أَمۡ أَمِنتُم مَّن فِي ٱلسَّمَآءِ أَن يُرۡسِلَ عَلَيۡكُمۡ حَاصِبٗاۖ فَسَتَعۡلَمُونَ كَيۡفَ نَذِيرِ ﴿١٧﴾
وَلَقَدۡ كَذَّبَ ٱلَّذِينَ مِن قَبۡلِهِمۡ فَكَيۡفَ كَانَ نَكِيرِ ﴿١٨﴾ أَوَلَمۡ يَرَوۡاْ إِلَى ٱلطَّيۡرِ فَوۡقَهُمۡ صَٰٓفَّٰتٖ
وَيَقۡبِضۡنَۚ مَا يُمۡسِكُهُنَّ إِلَّا ٱلرَّحۡمَٰنُۚ إِنَّهُۥ بِكُلِّ شَيۡءِۭ بَصِيرٌ ﴿١٩﴾

(16) ទ្រង់ធ្វើឱ្យផែនដីស្រូបទាញពួកអ្នកចុះក្រោមដូចដែលបានកើតឡើងចំពោះការូន។បន្ទាប់ពីទ្រង់បានបង្កើតវារាបស្មើសម្រាប់ពួកអ្នកដើរលើវា។នៅពេលនោះវារញ្ជួយញាប់ញ័ររញ្ជួយខុសពីអ្វីដែលធ្លាប់តែមានភាពនឹងនរនិងងាយស្រួល។
(17) ឬមួយពួកអ្នកគិតថាមានសុវត្ថិភាពបើសិនជាព្រះនៅលើមេឃគឺអល់ឡោះទ្រង់បញ្ជូនគ្រាប់ក្រួសមកប្រហារពួកអ្នកដូចដែលគេបានបញ្ជូនវាទៅកាន់ក្រុមលូត?ដូច្នេះពួកអ្នកនឹងដឹងពីការលំបាកពីទារុណកម្មថាតើការព្រមានរបស់យើងយ៉ាងដូចម្តេច?តែការដឹងខ្លួននេះហួសពេលហើយគ្មានប្រយោជន៍សម្រាប់ពួកអ្នកឡើយ។
(18) ហើយជាការពិតណាស់ពួកជំនាន់មុនពួកគេក៏បានបដិសេធនឹងបណ្តាអ្នកនាំសារដែរ។ហើយអល់ឡោះក៏បានបញ្ជូនទារុណកម្មមកលើពួកគេនូវអ្វីដែលពួកគេបានប្រឆាំងនិងបដិសេធ។នៅពេលពួកគេរងទារុណកម្មដ៏ឈឺចាប់នោះពួកគេនឹងដឹងថាយ៉ាងម៉េចលទ្ធផលនៃការបដិសេធរបស់ពួកគេចំពោះយើង។ពិតណាស់ទារុណកម្ម

នោះគឺខ្លាំងក្លាបំផុត។
19 តើពួកគេមិនបានសម្លឹងមើលសត្វដែលហើរត្រដាងស្លាបនិងក្តោបស្លាបរបស់ពួក
វានៅពីលើពួកគេទេឬ?គ្មានអ្នកណាអាចទ្រពួកវាមិនឱ្យធ្លាក់មកលើដីក្រៅពីអល់
ឡោះនោះឡើយ។ពិតប្រាកដណាស់ ទ្រង់មហាឃើញនូវអ្វីៗទាំងអស់។គ្មានអ្វីអាច
លាក់បាំងទ្រង់បានឡើយ។

أَمَّنۡ هَٰذَا ٱلَّذِى هُوَ جُندٌ لَّكُمۡ يَنصُرُكُم مِّن دُونِ ٱلرَّحۡمَٰنِۚ إِنِ ٱلۡكَٰفِرُونَ إِلَّا فِى غُرُورٍ ٢٠
أَمَّنۡ هَٰذَا ٱلَّذِى يَرۡزُقُكُمۡ إِنۡ أَمۡسَكَ رِزۡقَهُۥۚ بَل لَّجُّواْ فِى عُتُوٍّ وَنُفُورٍ ٢١
أَفَمَن يَمۡشِى مُكِبًّا عَلَىٰ وَجۡهِهِۦٓ أَهۡدَىٰٓ أَمَّن يَمۡشِى سَوِيًّا عَلَىٰ صِرَٰطٍ مُّسۡتَقِيمٍ ٢٢
قُلۡ هُوَ ٱلَّذِىٓ أَنشَأَكُمۡ وَجَعَلَ لَكُمُ ٱلسَّمۡعَ وَٱلۡأَبۡصَٰرَ وَٱلۡأَفۡـِٔدَةَۖ قَلِيلًا مَّا تَشۡكُرُونَ ٢٣
قُلۡ هُوَ ٱلَّذِى ذَرَأَكُمۡ فِى ٱلۡأَرۡضِ وَإِلَيۡهِ تُحۡشَرُونَ ٢٤ وَيَقُولُونَ مَتَىٰ هَٰذَا ٱلۡوَعۡدُ إِن
كُنتُمۡ صَٰدِقِينَ ٢٥ قُلۡ إِنَّمَا ٱلۡعِلۡمُ عِندَ ٱللَّهِ وَإِنَّمَآ أَنَا۠ نَذِيرٌ مُّبِينٌ ٢٦
فَلَمَّا رَأَوۡهُ زُلۡفَةً سِيٓـَٔتۡ وُجُوهُ ٱلَّذِينَ كَفَرُواْ وَقِيلَ هَٰذَا ٱلَّذِى كُنتُم بِهِۦ تَدَّعُونَ ٢٧

20 គ្មានទាហានណាអាចការពារពួកអ្នកពីទារុណកម្មរបស់អល់ឡោះបានឡើយ
ប្រសិនបើទ្រង់ចង់ដាក់ទារុណកម្មលើពួកអ្នក។ហើយពួកដែលគ្មានជំនឿគ្មានអ្វីក្រៅ
ពីស្ថិតនៅក្នុងការបោកប្រាស់របស់ស្ហៃតនតោះឡើយ។
21 ហើយក៏គ្មាននរណាអាចផ្តល់លាភសក្ការៈដល់ពួកអ្នកបានឡើយប្រសិនបើអល់
ឡោះបិទលាភសក្ការៈមិនឱ្យដល់ពួកអ្នក។ផ្ទុយទៅវិញពួកគេងប់ងុលនឹងភាពរឹងរូស
និងការក្រអឺតក្រទមមិនព្រមទទួលយកការពិត។
22 ដូច្នេះតើអ្នកដែលដើរឱនមុខរបស់គេមិនដឹងទិសដៅ(ពួកគ្មានជំនឿ)ទទួលបាន
ការចង្អុលបង្ហាញប្រសើរជាងឬមួយអ្នកដែលមានជំនឿដើរត្រង់ដឹងទិសដៅ
ច្បាស់លាស់នៅលើមាគ៌ាដ៏ត្រឹមត្រូវ?
23 ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ពួកគ្មានជំនឿដែលបដិសេធថាៈអល់ឡោះជា
អ្នកដែលបានបង្កើតពួកអ្នកហើយទ្រង់បានធ្វើឱ្យពួកអ្នកស្តាប់ឮនិងមើលឃើញនិង
មានបេះដូងចេះគិតពិចារណា។តិចតួចបំផុតនូវអ្វីដែលពួកអ្នកបានថ្លែងអំណរគុណ
លើលាភសក្ការៈដែលទ្រង់បានផ្តល់ឱ្យ។
24 ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ពួកគ្មានជំនឿដែលបដិសេធថាៈអល់ឡោះជាអ្នក
ដែលបានបង្កើតពួកអ្នកឱ្យមានជីវិតនៅលើផែនដីហើយពួកអ្នករីកសួសសាយពាស
ពេញផែនដី។រូបបដិមារបស់ពួកអ្នកមិនបានបង្កើតអ្វីមួយឡើយ។ហើយពួកអ្នកនឹងត្រូវ
ប្រមូលផ្តុំទៅកាន់ទ្រង់វិញនៅថ្ងៃបរលោកមិនមែនវិលទៅរករូបបដិមាឡើយ។
25 ហើយពួកដែលបដិសេធនឹងការធ្វើឱ្យរស់ឡើងវិញនោះបាននិយាយថាៈតើថ្ងៃ
សន្យាដែលពួកអ្នក(មូហាំម៉ាត់)និងក្រុមរបស់បានលើកឡើងនេះវាកើតឡើងនៅ
ពេលណា?ប្រសិនបើពួកអ្នកជាអ្នកនិយាយពិតមែននោះ។
26 មូហាំម៉ាត់ចូរប្រសាសន៍ចុះថាៈពេលវេលាកើតថ្ងៃបរលោកជាចំណេះដឹងមួយនៅ
ជាមួយនឹងអល់ឡោះគ្មានអ្នកណាដឹងពីថ្ងៃបរលោកនោះទេ។ហើយជាការពិតណាស់
ខ្ញុំគ្រាន់តែជាអ្នកដាស់តឿនព្រមានដ៏ច្បាស់លាស់ប៉ុណ្ណោះ។
27 នៅពេលដែលកិច្ចសន្យាបានមកដល់ខណៈដែលពួកគេបានឃើញទារុណកម្ម
នៅក្បែរពួកគេហើយនោះគឺជាថ្ងៃគីយ៉ាម៉ាត់ទឹកមុខរបស់ពួកដែលប្រឆាំងនោះប្រែជា




ខ្មៅ។ហើយមានគេនិយាយថា:នេះជាអ្វីដែលពួកអ្នកធ្លាប់បានទាមទារវាសុំឱ្យកើតឡើងនៅលើលោកិយ។

قُلۡ أَرَءَيۡتُمۡ إِنۡ أَهۡلَكَنِيَ ٱللَّهُ وَمَن مَّعِيَ أَوۡ رَحِمَنَا فَمَن يُجِيرُ ٱلۡكَٰفِرِينَ مِنۡ عَذَابٍ أَلِيمٖ ﴿٢٨﴾ قُلۡ هُوَ ٱلرَّحۡمَٰنُ ءَامَنَّا بِهِۦ وَعَلَيۡهِ تَوَكَّلۡنَاۖ فَسَتَعۡلَمُونَ مَنۡ هُوَ فِي ضَلَٰلٖ مُّبِينٖ ﴿٢٩﴾ قُلۡ أَرَءَيۡتُمۡ إِنۡ أَصۡبَحَ مَآؤُكُمۡ غَوۡرٗا فَمَن يَأۡتِيكُم بِمَآءٖ مَّعِينِۭ

(28) ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ពួកដែលប្រឆាំងបដិសេធនោះថា:ចូរពួកអ្នកប្រាប់ខ្ញុំមកប្រសិនបើអល់ឡោះបានធ្វើឱ្យខ្ញុំនិងអ្នកដែលរួមជំនឿជាមួយខ្ញុំស្លាប់ឬទ្រង់អាណិតស្រឡាញ់ពួកយើងតើមានអ្នកណាដែលអាចការពារពួកដែលប្រឆាំងអំពីទារុណកម្មដ៏ស្ទែនឈឺចាប់បាននោះ?គ្មាននរណាម្នាក់អាចការពារពួកគេពីទារុណកម្មដ៏ស្ទែនឈឺចាប់នោះបានឡើយ។

(29) ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ពួកដែលប្រឆាំងថា:ទ្រង់ជាម្ចាស់មហាសប្បុរសដែលពួកយើងអំពាវនាវទៅរកការគោរពសក្ការៈចំពោះទ្រង់តែមួយគត់និងមានជំនឿលើទ្រង់។ហើយចំពោះទ្រង់តែមួយគត់ដែលពួកយើងប្រគល់ការទុកចិត្តរាល់កិច្ចការទាំងអស់។ហើយពួកអ្នកនឹងដឹងថាតើអ្នកណាដែលស្ថិតក្នុងភាពវង្វេងដ៏ច្បាស់លាស់និងអ្នកណាស្ថិតក្នុងផ្លូវត្រឹមត្រូវនោះ?

(30) ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ពួកដែលប្រឆាំងថា:ចូរពួកអ្នកប្រាប់ខ្ញុំមកប្រសិនបើទឹកផឹករបស់ពួកអ្នកបានរីងស្ងួតតើមានអ្នកណាអាចនាំប្រភពទឹកមកឱ្យពួកអ្នកវិញ?គ្មាននរណាម្នាក់អាចធ្វើបានឡើយលើកលែងតែអល់ឡោះម្នាក់គត់។

## អាល់កឡាំ

**គោលបំណងនៃស៊ូរ៉ោះ** បង្ហាញពីចំណោះវិជ្ជានិងសីលធម៌របស់ណាពីនិងការគាំទ្រគាត់បន្ទាប់ពីការធ្វើបាបពីក្រុមប្រឆាំងលើគាត់។

**តាហ្វសៀរ**

نٓۚ وَٱلۡقَلَمِ وَمَا يَسۡطُرُونَ ﴿١﴾ مَآ أَنتَ بِنِعۡمَةِ رَبِّكَ بِمَجۡنُونٖ ﴿٢﴾ وَإِنَّ لَكَ لَأَجۡرًا غَيۡرَ مَمۡنُونٖ ﴿٣﴾ وَإِنَّكَ لَعَلَىٰ خُلُقٍ عَظِيمٖ ﴿٤﴾ فَسَتُبۡصِرُ وَيُبۡصِرُونَ ﴿٥﴾ بِأَييِّكُمُ ٱلۡمَفۡتُونُ ﴿٦﴾ إِنَّ رَبَّكَ هُوَ أَعۡلَمُ بِمَن ضَلَّ عَن سَبِيلِهِۦ وَهُوَ أَعۡلَمُ بِٱلۡمُهۡتَدِينَ

(1) ﴿ نٓ ﴾ ជាព្យញ្ជនៈមួយនៃអក្សរក្រមដូចនៅខាងដើមស៊ូរ៉ោះទាំងឡាយដែលផ្តើមដោយអក្សរក្រម។អល់ឡោះបានស្បថនឹងប៊ិកព្រមជាមួយនឹងអ្វីដែលមនុស្សកំពុងសរសេរដោយចុងប៊ិករបស់ពួកគេ។

(2) នែមូហាំម៉ាត់ដោយពរជ័យព្រះជាម្ចាស់របស់អ្នក អ្នកមិនមែនជាមនុស្សឆ្កួតនោះទេ។ ពរជ័យនោះគឺ ការតែងតាំងជាណាពីនិងស្អាតស្អំពីជំងឺឆ្កួតដែលពួកគេបានចោទប្រកាន់មកលើអ្នក។

(3) សម្រាប់អ្នកគឺផលបុណ្យច្រើនសន្ធឹកសន្ធាប់ដោយសារទំនួលខុសត្រូវដ៏ធ្ងន់ធ្ងរក្នុងនាមជាណាពីនិងការប្រឈមនឹងទុក្ខលំបាកទាំងឡាយគ្មានទីបញ្ចប់ឡើយឬគ្មានមនុស្សណាម្នាក់មានសគុណលើសអ្នក។

(4) ហើយពិតប្រាកដណាស់អ្នកមានអត្តចរិតដ៏ប្រពៃបំផុតអ្នកឋិតនៅលើសីលធម៌ដែលទ្រង់បានបង្គាប់ប្រើអ្នកក្នុងគម្ពីរអាល់គួរអាន។

(5) នែមូហាំម៉ាត់អ្នកនឹងឃើញហើយពួកដែលបដិសេធក៏នឹងឃើញដែរ។

6 នៅពេលការពិតបានលាតត្រដាងតើអ្នកណាក្នុងចំណោមពួកអ្នកជាមនុស្ស
វិកលចរិតនោះ ?
7 ពិតប្រាកដណាស់ម្ចាស់របស់អ្នកទ្រង់ដឹងបំផុតចំពោះអ្នកដែលបានវង្វេងចេញពី
មាគ៌ារបស់ទ្រង់។ហើយទ្រង់ក៏ដឹងបំផុតដែរចំពោះបណ្ដាអ្នកដែលទទួលបាននូវការ
ចង្អុលបង្ហាញ។ហើយទ្រង់ដឹងថាពួកគេជាអ្នកដែលវង្វេងហើយពួកអ្នកជាអ្នកដែល
ទទួលបានការចង្អុលបង្ហាញ។

فَلَا تُطِعِ ٱلْمُكَذِّبِينَ ﴿٨﴾ وَدُّوا۟ لَوْ تُدْهِنُ فَيُدْهِنُونَ ﴿٩﴾ وَلَا تُطِعْ كُلَّ حَلَّافٍ مَّهِينٍ ﴿١٠﴾ هَمَّازٍ
مَّشَّآءٍۭ بِنَمِيمٍ ﴿١١﴾ مَّنَّاعٍ لِّلْخَيْرِ مُعْتَدٍ أَثِيمٍ ﴿١٢﴾ عُتُلٍّۭ بَعْدَ ذَٰلِكَ زَنِيمٍ ﴿١٣﴾ أَن كَانَ ذَا مَالٍ
وَبَنِينَ ﴿١٤﴾ إِذَا تُتْلَىٰ عَلَيْهِ ءَايَٰتُنَا قَالَ أَسَٰطِيرُ ٱلْأَوَّلِينَ ﴿١٥﴾ سَنَسِمُهُۥ عَلَى ٱلْخُرْطُومِ ﴿١٦﴾

8 ដូច្នេះចូរអ្នក( មូ៉ហាំម៉ាត់ )កុំធ្វើតាមពួកដែលបដិសេធនឹងអ្វីដែលអ្នកបាននាំមក
ឱ្យសោះ។
9 ពួកគេប្រាថ្នាចង់ឱ្យអ្នកបន្ទន់ឥរិយាបថហើយពួកគេបន្ទន់ឥរិយាបថចំពោះអ្នកវិញដែ
រ។គេថាពួកគេចង់ឱ្យមានទំនោរទៅរកពួកគេនិងចង់ឱ្យអ្នកបោះបង់ការពិត។ពួកគេធ្វើជា
បន្ទន់ឥរិយាបថចំពោះអ្នកដើម្បីអូសទាញអ្នកឱ្យមានទំនោរពេញចិត្តនឹងពួកគេ។
10 ហើយចូរអ្នកកុំធ្វើតាមពួកដែលស្បថបំពានដែលថោកទាបបំផុតនោះឱ្យសោះ។
11 គឺអ្នកដែលចូលចិត្តបរិហារកេរ្តិ៍គេនិងចូលចិត្តដើរចាក់រុកគេឱ្យគេឈ្លោះទាស់ទែងគ្នា។
12 អ្នកដែលកំណាញ់ក្នុងផ្លូវល្អនិងចូលចិត្តបំពានលើមនុស្សទ្រព្យសម្បត្តិកេរ្តិ៍ឈ្មោះ
និងខ្លួនប្រាណគេនិងចូលចិត្តប្រព្រឹត្តបាបកម្ម។
13 គេជាមនុស្សដែលប្រឆាំងយ៉ាងខ្លាំងនិងគេជាមនុស្សឃោរឃៅបំផុត។
14 ដោយសារតែគេមានទ្រព្យសម្បត្តិនិងកូនជាច្រើនទើបធ្វើឱ្យពួកគេក្អេងក្អាងមិន
មានជំនឿចំពោះអល់ឡោះនិងរ៉សូលុលឡោះ។
15 នៅពេលដែលមានគេសូត្រអាយ៉ាត់ៗរបស់យើងឱ្យគេស្ដាប់គេបែរជានិយាយថាៈ
នេះគ្រាន់តែជារឿងនិទានរបស់អ្នកជំនាន់មុនប៉ុណ្ណោះ។
16 យើងនឹងបោះត្រាសញ្ញាពណ៌ខ្មៅលើច្រមុះរបស់គេធ្វើឱ្យភាពអាម៉ាស់នៅជាប់
នឹងខ្លួនគេរហូត។

إِنَّا بَلَوْنَٰهُمْ كَمَا بَلَوْنَآ أَصْحَٰبَ ٱلْجَنَّةِ إِذْ أَقْسَمُوا۟ لَيَصْرِمُنَّهَا مُصْبِحِينَ ﴿١٧﴾ وَلَا يَسْتَثْنُونَ ﴿١٨﴾ فَطَافَ عَلَيْهَا
طَآئِفٌ مِّن رَّبِّكَ وَهُمْ نَآئِمُونَ ﴿١٩﴾ فَأَصْبَحَتْ كَٱلصَّرِيمِ ﴿٢٠﴾ فَتَنَادَوْا۟ مُصْبِحِينَ ﴿٢١﴾ أَنِ ٱغْدُوا۟ عَلَىٰ
حَرْثِكُمْ إِن كُنتُمْ صَٰرِمِينَ ﴿٢٢﴾ فَٱنطَلَقُوا۟ وَهُمْ يَتَخَٰفَتُونَ ﴿٢٣﴾ أَن لَّا يَدْخُلَنَّهَا ٱلْيَوْمَ عَلَيْكُم مِّسْكِينٌ
﴿٢٤﴾ وَغَدَوْا۟ عَلَىٰ حَرْدٍ قَٰدِرِينَ ﴿٢٥﴾ فَلَمَّا رَأَوْهَا قَالُوٓا۟ إِنَّا لَضَآلُّونَ ﴿٢٦﴾ بَلْ نَحْنُ مَحْرُومُونَ ﴿٢٧﴾ قَالَ
أَوْسَطُهُمْ أَلَمْ أَقُل لَّكُمْ لَوْلَا تُسَبِّحُونَ ﴿٢٨﴾ قَالُوا۟ سُبْحَٰنَ رَبِّنَآ إِنَّا كُنَّا ظَٰلِمِينَ ﴿٢٩﴾ فَأَقْبَلَ بَعْضُهُمْ
عَلَىٰ بَعْضٍ يَتَلَٰوَمُونَ ﴿٣٠﴾ قَالُوا۟ يَٰوَيْلَنَآ إِنَّا كُنَّا طَٰغِينَ ﴿٣١﴾ عَسَىٰ رَبُّنَآ أَن يُبْدِلَنَا خَيْرًا مِّنْهَآ إِنَّآ
إِلَىٰ رَبِّنَا رَٰغِبُونَ ﴿٣٢﴾ كَذَٰلِكَ ٱلْعَذَابُ ۖ وَلَعَذَابُ ٱلْءَاخِرَةِ أَكْبَرُ ۚ لَوْ كَانُوا۟ يَعْلَمُونَ

17 អល់ឡោះបានសាកល្បងពួកកាហ្វៀរម៉ាក្កះធ្វើឱ្យពួកគេរងគ្រោះទុរភិក្សនិងគ្រោះ
រាំងស្ងួត។ដូចអល់ឡោះបានសាកល្បងពួកម្ចាស់ចម្ការខណៈដែលពួកគេបានស្បថថា
ពួកគេនឹងទៅប្រមូលផលទាំងព្រឹកព្រលឹមដោយមិនត្រូវបរិច្ចាកឱ្យអ្នកក្រីក្រឡើយ។
18 ដោយពួកគេមិននិយាយថាៈអិនស្ហាអល់ឡោះ( ប្រសិនបើអល់ឡោះមាន





ចេតនា)ឡើយ។
19 អល់ឡោះបានធ្វើឱ្យភ្លើងឆេះចម្ការនោះរហូតដល់ក្លាយជាផេះខណៈដែលពួកគេ
កំពុងដេកលក់ហើយពួកគេមិនអាចទប់ស្កាត់ភ្លើងនោះបានឡើយ។
20 ហើយចំការនោះក៏បានក្លាយជាពណ៌ខ្មៅដូចជាយប់ដែលងងឹតសូន្យសុង។
21 ពេលនោះពួកគេបានស្រែកហៅគ្នានៅពេលព្រឹកព្រលឹម។
22 ពួកគេបាននិយាយថា៖ចូរនាំគ្នាចេញដំណើរពីព្រឹកព្រលឹមទៅកាន់ចម្ការរបស់
ពួកអ្នកមុននឹងពួកអ្នកក្រមកដល់ៗប្រសិនបើពួកអ្នកចង់ប្រមូលផលនោះ។
23 ពេលនោះពួកគេក៏នាំគ្នាធ្វើដំណើរឆ្ពោះទៅចំការដោយពួកគេនិយាយគ្នាតិចៗ។
24 ពួកគេខ្សិបខ្សៀវគ្នាថា៖ថ្ងៃនេះមិនត្រូវឱ្យអ្នកក្រីក្រចូលមកក្នុងចំការរបស់ពួកអ្នក
ជាដាច់ខាត។
25 ហើយពួកគេស្រូតដំណើរតាំងពីព្រលឹមក្នុងគោលបំណងរារាំងអ្នកក្រីក្រមិនឱ្យ
ទទួលផលដោយពួកគេគិតថា:ពួកគេមានលទ្ធភាពធ្វើដូច្នោះ។
26 នៅពេលដែលពួកគេទៅដល់ឃើញចម្ការនោះត្រូវឆេះខ្ទិចពួកគេនិយាយថាយើង
វង្វេងផ្លូវមកខុសចម្ការរបស់យើងហើយៗ
27 តាមពិតអល់ឡោះបានបំផ្លាញផលដំណាំរបស់ពួកយើងដោយសារពួកយើងប្ដេ
ជ្ញាចិត្តមិនផ្ដល់ផលមួយចំណែកដល់ពួកអ្នកក្រីក្រ។
28 អ្នកដែលមានប្រាជ្ញាល្អជាងគេបាននិយាយថា៖តើខ្ញុំមិនបានប្រាប់ពួកអ្នកទេឬថា
ទង្វើរបស់ពួកអ្នកនេះជាការរំលោភបំពានទៅលើពួកអ្នកក្រីក្រ?ហេតុអ្វីបានជាពួក
អ្នកមិននាំគ្នាស្ញូត្រសូបហាណល់ឡោះនិងទទួលស្គាល់ភាពកំហុសភ្លាមៗទៅ?
29 ពួកគេនិយាយថាទ្រង់មហាស្អាតស្អំ!ពិតណាស់ពួកយើងគឺជាអ្នកខុស។មូល
ហេតុមកពីពួកយើងមិនព្រមផ្ដល់ផលមួយចំណែកដល់ពួកអ្នកទីទាល់ក្រ។
30 បន្ទាប់មកពួកគេបានដើរទៅរកគ្នាដោយស្ដីបន្ទោសគ្នាទៅវិញទៅមក។
31 ពួកគេបាននិយាយទាំងសោកស្ដាយថា៖ឱវិនាសអន្តរាយហើយពួកយើង!ពិត
ប្រាកដណាស់ពួកយើងគឺជាពួកដែលបំពានដោយពួកយើងមិនព្រមផ្ដល់ផលមួយ
ចំណែកដល់ពួកអ្នកទីទាល់ក្រ។
32 សង្ឃឹមថាម្ចាស់របស់ពួកយើងនឹងជំនួសឱ្យពួកយើងវិញនូវប្រការល្អជាងចំការ
នោះទៅទៀត។ពួកយើងប្រាថ្នាចង់ពរជ័យនិងការអភ័យទោសរបស់ទ្រង់តែមួយគត់
និងបួងសួងសុំការតបស្នងដែលល្អ។
33 ទារុណកម្មដោយការផ្ដាច់លាភសក្ការៈនេះគឺយើងនឹងធ្វើវាទៅលើអ្នកណាដែល
ប្រឆាំងនឹងយើងនៅលើលោកិយនេះតែប៉ុណ្ណោះ។ហើយទារុណកម្មនៅថ្ងៃបរលោក
វិញពិតជាធ្ងន់ធ្ងរជាងនេះទៅទៀតប្រសិនបើពួកគេបានដឹង។

إِنَّ لِلْمُتَّقِينَ عِندَ رَبِّهِمْ جَنَّٰتِ ٱلنَّعِيمِ ٣٤ أَفَنَجْعَلُ ٱلْمُسْلِمِينَ كَٱلْمُجْرِمِينَ ٣٥
مَا لَكُمْ كَيْفَ تَحْكُمُونَ ٣٦ أَمْ لَكُمْ كِتَٰبٌ فِيهِ تَدْرُسُونَ ٣٧ إِنَّ لَكُمْ فِيهِ لَمَا تَخَيَّرُونَ ٣٨
أَمْ لَكُمْ أَيْمَٰنٌ عَلَيْنَا بَٰلِغَةٌ إِلَىٰ يَوْمِ ٱلْقِيَٰمَةِ إِنَّ لَكُمْ لَمَا تَحْكُمُونَ ٣٩
سَلْهُمْ أَيُّهُم بِذَٰلِكَ زَعِيمٌ ٤٠ أَمْ لَهُمْ شُرَكَآءُ فَلْيَأْتُوا۟ بِشُرَكَآئِهِمْ إِن كَانُوا۟ صَٰدِقِينَ ٤١

34 ពិតប្រាកដណាស់បណ្ដាអ្នកដែលកោតខ្លាចអល់ឡោះដោយអនុវត្តតាមបទ
បញ្ជារបស់ទ្រង់និងជៀសវាងពីប្រការដែលទ្រង់ហាមឃាត់គឺទទួលបានឋានសួគ៌
ណាអ៊ីមពីម្ចាស់របស់ពួកគេដោយមានសុភមង្គលនៅក្នុងវាជានិច្ច។
35 តើយើងចាត់ទុកបណ្ដាអ្នកមូស្លីមដូចពួកដែលប្រព្រឹត្តបាបកម្មឬ?ក្នុងការទទួល



បានរង្វាន់ដូចអ្វីដែលពួកក្លាហៀរកូរ៉ៃស្សនៅម៉ាក្កះបានអះអាង ?
36 តើពួកអ្នកមានបញ្ហាអ្វីតើពួកអ្នកវិនិច្ឆ័យរឿងរ៉ាវមិនត្រឹមត្រូវយ៉ាងដូចម្ដេច ?
37 ឬក៏ពួកអ្នកមានគម្ពីរដែលចែងថាអ្នកប្រតិបត្តិអំពើល្អដូចគ្នានឹងអ្នកប្រព្រឹត្តបទល្មើសដែរ ?
38 ឬក្នុងគម្ពីរនោះពិតជាបានចែងថាពួកអ្នកអាចជ្រើសរើសយកអ្វីស្រេចតែចិត្តនៅថ្ងៃបរលោកមែនទេ ?
39 ឬមួយពួកអ្នកមានលិខិតសច្ចាធានាមួយអំពីយើង រហូតដល់ថ្ងៃបរលោកដែលអ្នកពិតជាអាចកាត់សេចក្ដីតាមអ្វីដែលពួកអ្នកចង់ឬ ?
40 នែមូហាំម៉ាត់ចូរសួរពួកដែលបាននិយាយពាក្យនេះថាតើនរណាជាអ្នកទទួលខុសត្រូវនិងធានាចំពោះរឿងនោះ ?
41 ឬពួកគេមានម្ចាស់ផ្សេងក្រៅពីអល់ឡោះដែលឱ្យរង្វាន់ដល់ពួកគេស្មើនឹងអ្នកមានជំនឿ ?បើដូច្នេះមែនចូរឱ្យពួកគេនាំម្ចាស់របស់ពួកគេនោះមក ប្រសិនបើពួកគេជាពួកដែលត្រឹមត្រូវលើអ្វីដែលពួកគេបានអះអាងថានឹងទទួលបានរង្វាន់ដូចអ្នកដែលមានជំនឿ។

يَوْمَ يُكْشَفُ عَن سَاقٍ وَيُدْعَوْنَ إِلَى ٱلسُّجُودِ فَلَا يَسْتَطِيعُونَ ﴿٤٢﴾ خَٰشِعَةً أَبْصَٰرُهُمْ
تَرْهَقُهُمْ ذِلَّةٌ ۖ وَقَدْ كَانُوا۟ يُدْعَوْنَ إِلَى ٱلسُّجُودِ وَهُمْ سَٰلِمُونَ ﴿٤٣﴾ فَذَرْنِى وَمَن يُكَذِّبُ بِهَٰذَا
ٱلْحَدِيثِ ۖ سَنَسْتَدْرِجُهُم مِّنْ حَيْثُ لَا يَعْلَمُونَ ﴿٤٤﴾ وَأُمْلِى لَهُمْ ۚ إِنَّ كَيْدِى مَتِينٌ ﴿٤٥﴾ أَمْ
تَسْـَٔلُهُمْ أَجْرًا فَهُم مِّن مَّغْرَمٍ مُّثْقَلُونَ ﴿٤٦﴾ أَمْ عِندَهُمُ ٱلْغَيْبُ فَهُمْ يَكْتُبُونَ ﴿٤٧﴾

42 នៅក្នុងថ្ងៃគីយ៉ាម៉ាត់អល់ឡោះបានបញ្ចេញកំភួនជើងរបស់ទ្រង់ហើយហៅឱ្យមនុស្សទាំងឡាយស៊ូជូទទៅចំពោះទ្រង់អ្នកមានជំនឿក៏បានស៊ូជូទនៅសល់តែពួកគ្មានជំនឿនិងពួកពុតត្បុតដែលមិនអាចស៊ូជូទបាន។
43 ភ្នែករបស់ពួកគេទម្លាក់ចុះខណៈដែលការលំបាកគ្របដណ្ដប់ពួកគេ។ហើយជាការពិតណាស់ពួកគេធ្លាប់ត្រូវបានគេអំពាវនាវឱ្យស៊ូជូទទៅចំពោះអល់ឡោះតែពួកគេមិនបានស៊ូជូទឡើយខណៈដែលពួកគេមានសុខភាពល្អនៅក្នុងពេលនោះ។
44 ដូច្នេះចូរអ្នក(មូហាំម៉ាត់)ទុកកិច្ចការនោះឱ្យយើង ហើយអ្នកណាដែលបដិសេធនឹងគម្ពីរគួរអានដែលបានបញ្ចុះមកលើអ្នកយើងនឹងទាញយកពួកគេបន្តិចម្ដងៗទៅរកភាពអន្តរាយដោយពួកគេមិនដឹងខ្លួនថានោះគឺជាការបញ្ឆោតអ្វីសទាញពួកគេឡើយ។
45 យើងពន្យារពេលឱ្យពួកគេធ្វើអំពើបាបកាន់តែច្រើន។ពិតណាស់ឧបាយកលរបស់យើងលើពួកគ្មានជំនឿនិងពួកបដិសេធខ្លាំងក្លាបំផុតគ្មានអ្វីរបូតចេញពីទ្រង់ឡើយហើយក៏មិនអាចគេចផុតពីទារុណកម្មបានដែរ។
46 តើអ្នក(មូហាំម៉ាត់)ទារថ្លៃឈ្នួលពីពួកគេសម្រាប់ការអំពាវនាវរបស់អ្នកមែនទេ ?ជាមូលហេតុដែលនាំឱ្យពួកគេទទួលបន្ទុកដ៏ធ្ងន់ធ្ងរនេះហើយជាមូលហេតុដែលនាំឱ្យពួកគេបដិសេធអំពីអ្នក ?តែតាមពិតវាផ្ទុយពីនោះ។អ្នកមិនបានទារថ្លៃឈ្នួលពីពួកគេឡើយ។តើអ្វីដែលរារាំងពួកគេមិនឱ្យតាមអ្នកបែបនេះ ?
47 ឬពួកគេដឹងរឿងអាថ៌កំបាំងហើយពួកគេសរសេរអំណះអំណាងទាំងឡាយដែលពួកគេបានអះអាងតាមចិត្តចង់របស់ពួកគេហើយពួកគេប្រកែកជាមួយនឹងអ្នកតាមអ្វីដែលពួកគេបានកត់ត្រាទុក។

فَٱصْبِرْ لِحُكْمِ رَبِّكَ وَلَا تَكُن كَصَاحِبِ ٱلْحُوتِ إِذْ نَادَىٰ وَهُوَ مَكْظُومٌ ﴿٤٨﴾




لَّوۡلَآ أَن تَدَٰرَكَهُۥ نِعۡمَةٞ مِّن رَّبِّهِۦ لَنُبِذَ بِٱلۡعَرَآءِ وَهُوَ مَذۡمُومٞ ﴿٤٩﴾ فَٱجۡتَبَٰهُ رَبُّهُۥ
فَجَعَلَهُۥ مِنَ ٱلصَّٰلِحِينَ ﴿٥٠﴾ وَإِن يَكَادُ ٱلَّذِينَ كَفَرُواْ لَيُزۡلِقُونَكَ بِأَبۡصَٰرِهِمۡ لَمَّا سَمِعُواْ
ٱلذِّكۡرَ وَيَقُولُونَ إِنَّهُۥ لَمَجۡنُونٞ ﴿٥١﴾ وَمَا هُوَ إِلَّا ذِكۡرٞ لِّلۡعَٰلَمِينَ ﴿٥٢﴾

48 ចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់ចំពោះច្បាប់នៃម្ចាស់ របស់អ្នកហើយចូរអ្នកកុំធ្វើដូច
អ្នកដែលនៅក្នុងពោះត្រីហ៊ូតណាពីយូនូសខណៈដែលគាត់មានភាពទន់ខ្សោយនឹងក្រុម
ក្រុមរបស់គាត់នៅពេលដែលគាត់បានបួងសួងសុំពីម្ចាស់របស់គាត់ខណៈដែលគាត់
ពោរពេញដោយក្តីទុក្ខព្រួយនៅក្នុងសមុទ្រហើយនៅក្នុងពោះត្រីហ៊ូតយ៉ាងងងឹត។
49 ប្រសិនបើគ្មាននៀកម៉ាត់ពីម្ចាស់របស់គាត់ទៅដល់គាត់ទេនោះម្ល៉េះត្រូវត្រីខ្វាក់
ចោលនៅទីវាលរហោដ្ឋានហើយគាត់ត្រូវគេស្តីបន្ទោស។
50 តែម្ចាស់របស់គាត់បានជ្រើសរើសគាត់(ជាអ្នក នាំសារ)ព្រមទាំងធ្វើឱ្យគាត់ស្ថិត
ក្នុងចំណោមអ្នកដែលសាងអំពើល្អត្រឹមត្រូវ។
51 ហើយពិតប្រាកដណាស់ពួកដែលគ្មានជំនឿនឹងអល់ឡោះហើយបដិសេធរ៉ស៊ូល
អល់ឡោះស្ទើរតែធ្វើឱ្យអ្នកមានគ្រោះថ្នាក់ដោយសារតែការសម្លឹងមើលរបស់ពួកគេនៅ
ពេលដែលពួកគេបានស្តាប់ពុគម្ពីរគួរអានដែលបញ្ចុះមកឱ្យអ្នក។ហើយពួកគេថែម
ទាំងនិយាយទៀតថាតណ្ហានិងក្តារបដិសេធពីការពិតរបស់ពួកគេថា៖ពិតប្រាកដ
ណាស់អ្នកនាំសារគឺជាមនុស្សវិកលចរិត។
52 ហើយគម្ពីរគួរអានដែលបានបញ្ចុះមកលើអ្នកគឺគ្មានអ្វីក្រៅពីការទូន្មាននិងការ
រំលឹកដល់មនុស្សនិងជិនទាំងអស់នោះទេឡើយ។

## អាល់ហាគកោះ

**គោលបំណងនៃស៊ូរោះ**ថ្ងៃគីយ៉ាម៉ាត់នឹងកើតឡើងដោយមិនអាចជៀសផុតដោយ
មានការបញ្ជាក់យ៉ាងពិតប្រាកដពីគម្ពីគួរអានហើយអ្នកដែលមានជំនឿនឹងសប្បាយ
រីករាយចំណែកអ្នកគ្មានជំនឿនឹងមានទុក្ខព្រួយ។

**តាហ្សៀរ**

ٱلۡحَآقَّةُ ﴿١﴾ مَا ٱلۡحَآقَّةُ ﴿٢﴾ وَمَآ أَدۡرَىٰكَ مَا ٱلۡحَآقَّةُ ﴿٣﴾ كَذَّبَتۡ ثَمُودُ وَعَادُۢ بِٱلۡقَارِعَةِ ﴿٤﴾ فَأَمَّا ثَمُودُ
فَأُهۡلِكُواْ بِٱلطَّاغِيَةِ ﴿٥﴾ وَأَمَّا عَادٞ فَأُهۡلِكُواْ بِرِيحٖ صَرۡصَرٍ عَاتِيَةٖ ﴿٦﴾ سَخَّرَهَا عَلَيۡهِمۡ سَبۡعَ لَيَالٖ
وَثَمَٰنِيَةَ أَيَّامٍ حُسُومٗاۖ فَتَرَى ٱلۡقَوۡمَ فِيهَا صَرۡعَىٰ كَأَنَّهُمۡ أَعۡجَازُ نَخۡلٍ خَاوِيَةٖ ﴿٧﴾ فَهَلۡ تَرَىٰ لَهُم مِّنۢ بَاقِيَةٖ
﴿٨﴾ وَجَآءَ فِرۡعَوۡنُ وَمَن قَبۡلَهُۥ وَٱلۡمُؤۡتَفِكَٰتُ بِٱلۡخَاطِئَةِ ﴿٩﴾ فَعَصَوۡاْ رَسُولَ رَبِّهِمۡ فَأَخَذَهُمۡ أَخۡذَةٗ
رَّابِيَةً ﴿١٠﴾ إِنَّا لَمَّا طَغَا ٱلۡمَآءُ حَمَلۡنَٰكُمۡ فِي ٱلۡجَارِيَةِ ﴿١١﴾ لِنَجۡعَلَهَا لَكُمۡ تَذۡكِرَةٗ وَتَعِيَهَآ أُذُنٞ وَٰعِيَةٞ

1 អល់ឡោះរំលឹកដល់មនុស្សលោកទាំងអស់ថាថ្ងៃបរលោកជាថ្ងៃដែលនឹងកើត
ឡើងពិតប្រាកដ។
2 នាប់មកទ្រង់ក៏បានសួរដោយលើកដំកើងកិច្ចការនោះថាអ្វីទៅជាថ្ងៃបរលោកនោះ?
3 ហើយអ្វីដែលធ្វើឱ្យអ្នកដឹងថាវាជាថ្ងៃបរលោកនោះ?
4 ពួកសាមូតក្រុមណាពីសរទ្បេះនិងពួកអាតក្រុមណាពីហ៊ូទបានបដិសេធចំពោះថ្ងៃ
បរលោកជាថ្ងៃដែលមនុស្សមានភាពភ័យខ្លាចដោយភាពធ្ងន់ធ្ងរនៃភាពរន្ធត់របស់វា។
5 ឯចំណែកពួកសាមូតត្រូវបានអល់ឡោះបំផ្លាញពួកគេដោយសូរស្រែមែកយ៉ាងខ្លាំង។
6 រីឯពួកអាតវិញត្រូវបានអល់ឡោះបំផ្លាញពួកគេដោយខ្យល់ព្យុះដ៏ត្រជាក់បំផុត




បក់បោកពួកគេយ៉ាងខ្លាំង។
7 ទ្រង់បានបញ្ជូនព្យុះនេះមករយៈពេលប្រាំពីរយប់ប្រាំបីថ្ងៃជាប់ៗគ្នាដើម្បីបំផ្លាញ់
ពួកគេ។ហើយអ្នកនឹងឃើញពួកគេក្នុងស្រុកភូមិរបស់ពួកគេដួលស្លាប់នៅលើដី។ពួក
គេដេកស្លាប់ដូចដើមឈើដែលដួលរលំ។
8 តើអ្នកឃើញពួកគេនៅសេសសល់ដែរឬទេបន្ទាប់ពីពួកគេទទួលនូវទារុណកម្ម?
9 ហើយហ្វៀរអោននិងក្រុមដែលមុនពួកគេនិងអ្នកស្រុកដែលត្រូវបានគេធ្វើ
ទារុណកម្មគឺក្រុមណាពីលូតសុទ្ធតែបានប្រព្រឹត្តបាបកម្មអំពីអំពើស្ស៊ីរិកនិងធ្វើអំពើបទ
ល្មើស។
10 ហើយពួកគេទាំងអស់នោះបានប្រឆាំងនឹងអ្នកនាំសារដែលគេបានតែងតាំងទៅ
លើពួកគេ។អល់ឡោះបានដាក់ទោសពួកគេយ៉ាងធ្ងន់ធ្ងរបំផុតដើម្បីបំផ្លាញ់ពួកគេ។
11 នៅពេលទឹកជំនន់លិចឡើងខ្ពស់បំផុតយើងបានផ្ទុកពួកអ្នកក្នុងសំពៅដែលណាពី
នួសបានធ្វើវាតាមបទបញ្ជារបស់យើងសម្រាប់ផ្ទុកពួកអ្នក។
12 យើងបានយករឿងសំពៅនេះដើម្បីជាមេរៀនបង្ហាញឱ្យឃើញពីការវិនាសរបស់
ពួកគ្មានជំនឿហើយនិងភាពជោគជ័យរបស់អ្នកមានជំនឿ។ហើយមានតែត្រចៀក
ដែលពូកែចាំប៉ុណ្ណោះដែលស្តាប់ហើយចងចាំអ្វីដែលបានស្តាប់លឺ។

فَإِذَا نُفِخَ فِي ٱلصُّورِ نَفۡخَةٞ وَٰحِدَةٞ ﴿١٣﴾ وَحُمِلَتِ ٱلۡأَرۡضُ وَٱلۡجِبَالُ فَدُكَّتَا دَكَّةٗ وَٰحِدَةٗ ﴿١٤﴾
فَيَوۡمَئِذٖ وَقَعَتِ ٱلۡوَاقِعَةُ ﴿١٥﴾ وَٱنشَقَّتِ ٱلسَّمَآءُ فَهِيَ يَوۡمَئِذٖ وَاهِيَةٞ ﴿١٦﴾ وَٱلۡمَلَكُ عَلَىٰٓ أَرۡجَآئِهَاۚ وَيَحۡمِلُ
عَرۡشَ رَبِّكَ فَوۡقَهُمۡ يَوۡمَئِذٖ ثَمَٰنِيَةٞ ﴿١٧﴾ يَوۡمَئِذٖ تُعۡرَضُونَ لَا تَخۡفَىٰ مِنكُمۡ خَافِيَةٞ ﴿١٨﴾

13 ហើយនៅពេលដែលម៉ាឡាអ៊ីកាត់ផ្លុំត្រែបានផ្លុំលើកទីមួយ។
14 ហើយផែនដីនិងភ្នំត្រូវបានគេលើកឡើងហើយទាំងដីទាំងភ្នំត្រូវបំផ្លាញខ្ទេចខ្ទី
ម្តងទាំងអស់។
15 ថ្ងៃបរលោកកើតឡើងនៅខណៈនោះតែម្តង។
16 មេឃបានបាក់ខ្ទេចខ្ទីដោយសារពួកម៉ាឡាអ៊ីកាត់ដែលនៅលើមេឃបានចុះមក។
ហើយនៅថ្ងៃនោះមេឃប្រែក្លាយជាទន់ខ្សោយខុសពីមុនជាតែខ្លាំងរឹងមាំ។
17 ពួកម៉ាឡាអ៊ីកាត់ទាំងឡាយឋិតនៅគ្រប់ជ្រុងនៃមេឃ។ហើយនៅថ្ងៃនោះមានម៉ា
ឡាអ៊ីកាត់ប្រាំបីនាក់កំពុងទ្រូបល្លង្គព្រះជាម្ចាស់របស់អ្នកសុទ្ធតែជាជំនិតរបស់ទ្រង់។
18 នៅថ្ងៃនោះគេយកខ្ញុំបម្រើរបស់ទ្រង់ទាំងអស់មកបង្ហាញខ្លួននៅមុខអល់ឡោះគ្មានអ្វី
លាក់បាំងនឹងអល់ឡោះបានឡើយផ្ទុយទៅវិញគឺអល់ឡោះដឹងជ្រួតជ្រាប់ទាំងអស់។

فَأَمَّا مَنۡ أُوتِيَ كِتَٰبَهُۥ بِيَمِينِهِۦ فَيَقُولُ هَآؤُمُ ٱقۡرَءُواْ كِتَٰبِيَهۡ ﴿١٩﴾
إِنِّي ظَنَنتُ أَنِّي مُلَٰقٍ حِسَابِيَهۡ ﴿٢٠﴾ فَهُوَ فِي عِيشَةٖ رَّاضِيَةٖ ﴿٢١﴾ فِي جَنَّةٍ عَالِيَةٖ ﴿٢٢﴾
قُطُوفُهَا دَانِيَةٞ ﴿٢٣﴾ كُلُواْ وَٱشۡرَبُواْ هَنِيٓـَٔۢا بِمَآ أَسۡلَفۡتُمۡ فِي ٱلۡأَيَّامِ ٱلۡخَالِيَةِ ﴿٢٤﴾

19 រីឯអ្នកដែលត្រូវបានគេប្រគល់សៀវភៅកំណត់ហេតុរបស់គេនៅដៃស្តាំរបស់គេ
នោះគេនឹងនិយាយទាំងសប្បាយរីករាយថា៖ចូរពួកអ្នកយកសៀវភៅកំណត់ហេតុ
របស់ខ្ញុំទៅអានចុះ។
20 ពិតប្រាកដណាស់ខ្ញុំជឿជាក់យ៉ាងច្បាស់ថាខ្ញុំពិតជានឹងត្រូវបានគេធ្វើឱ្យរស់ឡើង
វិញនិងពិតជានឹងត្រូវគេជំនុំជម្រះ។
21 ហើយគេនឹងរស់នៅដោយក្តីគាប់ចិត្តជាទីបំផុតនូវអ្វីដែលគេបានឃើញអំពីលាភ
សក្ការៈដែលគ្មានទីបញ្ចប់។




22 នៅក្នុងឋានសួគ៌ដ៏ខ្ពង់ខ្ពស់។
23 ផ្លែឈើគ្រប់ប្រភេទឋិតនៅជិតបង្អើយចង់បេះពេលណាក៏បាន។
24 គេបាននិយាយទៅកាន់ពួកគេដោយការគោរពថា៖ ចូរពួកអ្នកបរិភោគនិងផឹកដោយ
រីករាយដោយសារតែអំពើល្អដែលពួកអ្នកធ្លាប់បានសាងកន្លងមកនៅក្នុងលោកិយ។

وَأَمَّا مَنْ أُوتِيَ كِتَٰبَهُۥ بِشِمَالِهِۦ فَيَقُولُ يَٰلَيْتَنِي لَمْ أُوتَ كِتَٰبِيَهْ ﴿٢٥﴾ وَلَمْ أَدْرِ مَا حِسَابِيَهْ ﴿٢٦﴾
يَٰلَيْتَهَا كَانَتِ ٱلْقَاضِيَةَ ﴿٢٧﴾ مَآ أَغْنَىٰ عَنِّي مَالِيَهْۜ ﴿٢٨﴾ هَلَكَ عَنِّي سُلْطَٰنِيَهْ ﴿٢٩﴾ خُذُوهُ فَغُلُّوهُ ﴿٣٠﴾
ثُمَّ ٱلْجَحِيمَ صَلُّوهُ ﴿٣١﴾ ثُمَّ فِي سِلْسِلَةٍ ذَرْعُهَا سَبْعُونَ ذِرَاعًا فَٱسْلُكُوهُ ﴿٣٢﴾
إِنَّهُۥ كَانَ لَا يُؤْمِنُ بِٱللَّهِ ٱلْعَظِيمِ ﴿٣٣﴾ وَلَا يَحُضُّ عَلَىٰ طَعَامِ ٱلْمِسْكِينِ ﴿٣٤﴾
فَلَيْسَ لَهُ ٱلْيَوْمَ هَٰهُنَا حَمِيمٌ ﴿٣٥﴾ وَلَا طَعَامٌ إِلَّا مِنْ غِسْلِينٍ ﴿٣٦﴾ لَّا يَأْكُلُهُۥٓ إِلَّا ٱلْخَٰطِـُٔونَ ﴿٣٧﴾

25 រីឯអ្នកដែលគេបានប្រគល់នូវសៀវភៅកំណត់ហេតុរបស់គេនៅដៃឆ្វេងរបស់គេ។ គេនឹង
និយាយទាំងសោកស្តាយយ៉ាងខ្លាំងថា៖ ឱអនិច្ចាខ្លួនខ្ញុំអើយ! សង្ឃឹមថាខ្ញុំមិនត្រូវគេប្រគល់
សៀវភៅកំណត់ហេតុដ៏អាក្រក់របស់ខ្ញុំដែលនឹងត្រូវទទួលទារុណកម្មនេះឡើយ។
26 ឱអនិច្ចាខ្លួនខ្ញុំអើយខ្ញុំក៏មិនទាន់ដឹងដែរថាអ្វីទៅជាលទ្ធផលរបស់ខ្ញុំនោះ។
27 ឱអនិច្ចា! សង្ឃឹមថាស្រេចក្តីស្លាប់របស់ខ្ញុំក្នុងលោកិយបានបញ្ចប់អ្វីៗទាំងអស់
ដោយគ្មានការរស់ឡើងវិញឡើយ។
28 ទ្រព្យសម្បត្តិរបស់ខ្ញុំមិនអាចការពារខ្ញុំពីទារុណកម្មរបស់អល់ឡោះបន្តិចណាឡើយ។
29 ខ្ញុំអស់លេសនឹងតវ៉ាហើយអំណាចរបស់ខ្ញុំក៏បានបាត់បង់ពីខ្ញុំដែរ។
30 មានគេនិយាយទៅកាន់ម៉ាឡាអ៊ីកាត់យាមទ្វារនរកថា៖ ចូរអ្នកចាប់ជននេះរួច
ដាក់ច្រវាក់កនិងដៃគេ។
31 បន្ទាប់មកបោះគេចូលក្នុងភ្លើងនរកចុះឱ្យគេភ្លក់នូវកម្តៅរបស់វា។
32 បន្ទាប់មកចូរយកច្រវាក់ដែលដែលមានប្រវែង៧០ហត្ថចាក់ដោតគេ។
33 ពិតប្រាកដណាស់គេមិនធ្លាប់មានជំនឿលើអល់ឡោះដ៏មហាធំធេងឡើយ។
34 ហើយគេមិនដែលជំរុញគ្នាលើការផ្តល់ចំណីអាហារដល់អ្នកក្រីក្រឡើយ។
35 នៅថ្ងៃបរលោកគេគ្មានសាច់ញាតិណាជួយសង្គ្រោះគេពីទារុណកម្មឡើយ។
36 ហើយសម្រាប់គេគ្មានចំណីអាហារណាក្រៅពីឈាមខ្ទុះដែលហូរចេញពីខ្លួនអ្នក
ដែលនៅឋាននរក។
37 គ្មានអ្នកណាស៊ីទឹកខ្ទុះនេះក្រៅពីពួកអ្នកដែលប្រព្រឹត្តបាបកម្មឡើយ។

فَلَآ أُقْسِمُ بِمَا تُبْصِرُونَ ﴿٣٨﴾ وَمَا لَا تُبْصِرُونَ ﴿٣٩﴾ إِنَّهُۥ لَقَوْلُ رَسُولٍ كَرِيمٍ ﴿٤٠﴾ وَمَا هُوَ بِقَوْلِ
شَاعِرٍ قَلِيلًا مَّا تُؤْمِنُونَ ﴿٤١﴾ وَلَا بِقَوْلِ كَاهِنٍ قَلِيلًا مَّا تَذَكَّرُونَ ﴿٤٢﴾ تَنزِيلٌ مِّن رَّبِّ ٱلْعَٰلَمِينَ ﴿٤٣﴾

38 អល់ឡោះស្បថនឹងអ្វីគ្រប់យ៉ាងដែលពួកអ្នកឃើញ។
39 ហើយស្បថនឹងអ្វីគ្រប់យ៉ាងដែលពួកអ្នកមិនឃើញ។
40 ពិតប្រាកដណាស់គម្ពីរគួរអានគឺជាពាក្យពេចន៍ របស់អល់ឡោះដែលសូត្រដោយ
អ្នកនាំសារដ៏មហាថ្កុំថ្កើងទៅកាន់មនុស្សលោក។
41 ហើយវាមិនមែនជាពាក្យពេចន៍របស់អ្នកកវីឡើយ។ ពីព្រោះវាមិនដូចជាលក្ខណៈ
កំណាព្យឡើយតែអ្វីដែលពួកអ្នកជឿនោះគឺតិចតួចបំផុត។
42 ហើយក៏មិនមែនជាពាក្យពេចន៍របស់គ្រូទាយដែរ។ ពីព្រោះពាក្យពេចន៍របស់គ្រូ
ទាយវាជាកិច្ចផ្សេងពីគម្ពីគួរអាន។ តែអ្វីដែលពួកអ្នកនឹកឃើញនោះគឺតិចតួចបំផុត។

43 ប៉ុន្តែវាជាពាក្យពេចន៍ដែលគេបញ្ចុះមកពីព្រះជាម្ចាស់នៃសកលលោកទាំងមូល។

وَلَوۡ تَقَوَّلَ عَلَيۡنَا بَعۡضَ ٱلۡأَقَاوِيلِ ﴿٤٤﴾ لَأَخَذۡنَا مِنۡهُ بِٱلۡيَمِينِ ﴿٤٥﴾ ثُمَّ لَقَطَعۡنَا مِنۡهُ ٱلۡوَتِينَ ﴿٤٦﴾
فَمَا مِنكُم مِّنۡ أَحَدٍ عَنۡهُ حَٰجِزِينَ ﴿٤٧﴾ وَإِنَّهُۥ لَتَذۡكِرَةٌ لِّلۡمُتَّقِينَ ﴿٤٨﴾
وَإِنَّا لَنَعۡلَمُ أَنَّ مِنكُم مُّكَذِّبِينَ ﴿٤٩﴾ وَإِنَّهُۥ لَحَسۡرَةٌ عَلَى ٱلۡكَٰفِرِينَ ﴿٥٠﴾
وَإِنَّهُۥ لَحَقُّ ٱلۡيَقِينِ ﴿٥١﴾ فَسَبِّحۡ بِٱسۡمِ رَبِّكَ ٱلۡعَظِيمِ ﴿٥٢﴾

44 បើសិនជារ៉ស៊ូលុលទ្បោះមូហាំម៉ាត់និយាយប្រឌិតលើពាក្យពេចន៍មួយចំនួនដែលយើងមិនបាននិយាយ។
45 យើងនឹងផ្តន្ទាទោសគេដោយដៃស្តាំរបស់យើង។
46 បន្ទាប់មកយើងនឹងកាត់ផ្តាច់សរសៃឈាមបេះដូងរបស់គេ។
47 គ្មាននរណាម្នាក់អាចរារាំងយើងឬអាចរំដោះគេឱ្យរួចផុតពីយើងបានឡើយ។បើអ៊ីចឹងតើគេខំធ្វើកុហកបោកប្រាស់ចំពោះអល់ទ្បោះដើម្បីពួកអ្នកធ្វើអ្វី?
48 គម្ពីអាលគួរអានគឺជាការដាស់រំឭកដល់ពួកអ្នកដែលកោតខ្លាចអល់ទ្បោះដោយអនុវត្តន៍តាមប្រទបញ្ញារបស់ទ្រង់និងជៀសវាងពីប្រការដែលទ្រង់ហាមឃាត់។
49 ពិតណាស់យើងដឹងយ៉ាងច្បាស់ថាក្នុងចំណោមពួកអ្នកមានអ្នកដែលបដិសេធនឹងគម្ពីគួរអាននេះ។
50 ពិតណាស់ការបដិសេធនឹងគម្ពីអាលគួរអានគឺជាការសោកស្តាយនិងជាវិប្បដិសារីយ៉ាងខ្លាំងបំផុតនៅថ្ងៃបរលោក។
51 ហើយពិតប្រាកដណាស់វាគឺជាពាក្យសម្តីមកពីអល់ទ្បោះយ៉ាងពិតប្រាកដដោយគ្មានភាពមន្ទិលសង្ស័យជុំវិញគម្ពីរនេះឡើយ។
52 ចូរអ្នក(មូហាំម៉ាត់)លើកតម្កើងនាមនៃម្ចាស់របស់ អ្នកដ៏មហាឧត្តុង្គឧត្តម។

# អាល់ម៉ាអារិច

**គោលបំណងនៃស៊ូរ៉ោះ:** ទារុណកម្មនឹងកើតមានឡើងជាដាច់ខាត់លើអ្នកដែលប្រឆាំង ហើយលាភសក្ការៈនឹងមានដល់អ្នកដែលមានជំនឿនៅថ្ងៃបរលោក។

**តាហ្សៀរ**

سَأَلَ سَآئِلُۢ بِعَذَابٖ وَاقِعٖ ﴿١﴾ لِّلۡكَٰفِرِينَ لَيۡسَ لَهُۥ دَافِعٞ ﴿٢﴾ مِّنَ ٱللَّهِ ذِي ٱلۡمَعَارِجِ ﴿٣﴾
تَعۡرُجُ ٱلۡمَلَٰٓئِكَةُ وَٱلرُّوحُ إِلَيۡهِ فِي يَوۡمٖ كَانَ مِقۡدَارُهُۥ خَمۡسِينَ أَلۡفَ سَنَةٖ ﴿٤﴾
فَٱصۡبِرۡ صَبۡرٗا جَمِيلًا ﴿٥﴾ إِنَّهُمۡ يَرَوۡنَهُۥ بَعِيدٗا ﴿٦﴾ وَنَرَىٰهُ قَرِيبٗا

1 មានបុរសម្នាក់បួងសួងសុំឱ្យទារុណកម្មកើតមានឡើងទៅលើខ្លួនគេនិងក្រុមរបស់គេប្រសិនបើទារុណកម្មមានពិត។នេះជាការចំអកពីរូបគេ។តែទារុណកម្មនឹងមានពិតនៅថ្ងៃបរលោក។
2 ចំពោះពួកដែលគ្មានជំនឿនឹងអល់ទ្បោះគឺគ្មានអ្នកណាម្នាក់អាចការពារគេពីទារុណកម្មនេះបានឡើយ។
3 ពីអល់ទ្បោះដែលជាម្ចាស់នៃជណ្តើរឡើងដ៏ធំមហិមា។
4 ដែលម៉ាឡាអ៊ីកាត់និងជីព្រីលឡើងទៅកាន់ទ្រង់តាមជណ្តើរដ៏ធំមហិមានេះក្នុងថ្ងៃបរលោកវាជាថ្ងៃដែលរយៈពេលរបស់វាចំនួនហាសិបពាន់ឆ្នាំ។
5 ចូរអត់ធ្មត់(មូហាំម៉ាត់)ឱ្យបានល្អប្រសើរដោយគ្មានការភ័យខ្លាចនិងមិនត្រូវត្អូញត្អែរឡើយ។





6 ពិតប្រាកដណាស់ពួកគេឃើញទារុណកម្មនៅឆ្ងាយបំផុតមិនអាចកើតឡើងបានទេ។
7 តែយើងឃើញវានៅជិតបង្កើយ។

يَوْمَ تَكُونُ ٱلسَّمَآءُ كَٱلْمُهْلِ ﴿٨﴾ وَتَكُونُ ٱلْجِبَالُ كَٱلْعِهْنِ ﴿٩﴾ وَلَا يَسْـَٔلُ حَمِيمٌ حَمِيمًا ﴿١٠﴾
يُبَصَّرُونَهُمْ ۚ يَوَدُّ ٱلْمُجْرِمُ لَوْ يَفْتَدِى مِنْ عَذَابِ يَوْمِئِذٍۭ بِبَنِيهِ ﴿١١﴾
وَصَٰحِبَتِهِۦ وَأَخِيهِ ﴿١٢﴾ وَفَصِيلَتِهِ ٱلَّتِى تُـْٔوِيهِ ﴿١٣﴾ وَمَن فِى ٱلْأَرْضِ جَمِيعًا ثُمَّ يُنجِيهِ ﴿١٤﴾
كَلَّآ ۖ إِنَّهَا لَظَىٰ ﴿١٥﴾ نَزَّاعَةً لِّلشَّوَىٰ ﴿١٦﴾ تَدْعُوا۟ مَنْ أَدْبَرَ وَتَوَلَّىٰ ﴿١٧﴾ وَجَمَعَ فَأَوْعَىٰٓ

8 ថ្ងៃដែលមេឃប្រែក្លាយជារលាយដូចគេដុតរំលាយស្ពាន់ មាសនិងអ្វីផ្សេងទៀត។
9 ហើយភ្នំទាំងឡាយប្រែក្លាយដូចជារោមសត្វចម្រុះពណ៌។
10 នៅថ្ងៃនោះគ្មានសាច់ញាតិណាមួយសួរសុខទុក្ខគ្នាទេ។ដោយសារពួកគេរវល់រៀ
ងៗខ្លួន។
11 មនុស្សគ្រប់រូបមើលឃើញគ្នាសាច់ញាតិរបស់គេគ្មានបាត់ម្នាក់ណាឡើយ។ទោះជា
បែបនេះក៏ដោយក៏ពួកគេមិនបានសួរសុខទុក្ខគ្នាឡើយដោយសារស្ថានភាពតានតឹងខ្លាំង។
ពួកគេមានបំណងលោះខ្លួនឱ្យរួចផុតពីទារុណកម្មនៅថ្ងៃនោះដោយកូនចៅរបស់គេ។
12 ការលោះនិងប្រពន្ធរបស់គេនិងបងប្អូនរបស់គេ។
13 ការលោះនិងក្រុមគ្រួសារសាច់សារលោហិតរបស់គេដែលពឹងពាក់គ្នាពេលមាន
គ្រោះថ្នាក់។
14 ការលោះនិងអ្នកនៅលើភពផែនដីទាំងមូលមនុស្សជិននិងអ្នកផ្សេងទៀត។
ដោយការលោះនេះធ្វើឱ្យគេរួចផុតពីទារុណកម្មភ្លើងនរក។
15 តែមិនដូចអ្វីដែលពួកឧក្រិដ្ឋជនប្រាថ្នាឡើយ។ពិតណាស់វាជាភ្លើងដែលឆាបឆេះ
សន្ធោសន្ធៅនៅថ្ងៃបរលោក។
16 ដែលវាបានបកស្បែកក្បាលជាផ្នែកៗដោយសារតែកម្តៅដ៏ខ្លាំងក្លារបស់វា។
17 វា(នរក)បានស្រែកហៅអ្នកដែលបែរខ្នងអ្នករត់គេចពីមាគ៌ាត្រឹមត្រូវមិនមាន
ជំនឿនឹងវានិងមិនអនុវត្តតាម។
18 ហើយបានប្រមូលទ្រព្យសម្បត្តិលាក់ទុកមិនបរិច្ចាគទានតាមមាគ៌អល់ឡោះ។

إِنَّ ٱلْإِنسَٰنَ خُلِقَ هَلُوعًا ﴿١٩﴾ إِذَا مَسَّهُ ٱلشَّرُّ جَزُوعًا ﴿٢٠﴾ وَإِذَا مَسَّهُ ٱلْخَيْرُ مَنُوعًا ﴿٢١﴾
إِلَّا ٱلْمُصَلِّينَ ﴿٢٢﴾ ٱلَّذِينَ هُمْ عَلَىٰ صَلَاتِهِمْ دَآئِمُونَ ﴿٢٣﴾ وَٱلَّذِينَ فِىٓ أَمْوَٰلِهِمْ حَقٌّ مَّعْلُومٌ ﴿٢٤﴾
لِّلسَّآئِلِ وَٱلْمَحْرُومِ ﴿٢٥﴾ وَٱلَّذِينَ يُصَدِّقُونَ بِيَوْمِ ٱلدِّينِ ﴿٢٦﴾ وَٱلَّذِينَ هُم مِّنْ عَذَابِ رَبِّهِم مُّشْفِقُونَ
﴿٢٧﴾ إِنَّ عَذَابَ رَبِّهِمْ غَيْرُ مَأْمُونٍ ﴿٢٨﴾ وَٱلَّذِينَ هُمْ لِفُرُوجِهِمْ حَٰفِظُونَ ﴿٢٩﴾
إِلَّا عَلَىٰٓ أَزْوَٰجِهِمْ أَوْ مَا مَلَكَتْ أَيْمَٰنُهُمْ فَإِنَّهُمْ غَيْرُ مَلُومِينَ ﴿٣٠﴾ فَمَنِ ٱبْتَغَىٰ وَرَآءَ ذَٰلِكَ
فَأُو۟لَٰٓئِكَ هُمُ ٱلْعَادُونَ ﴿٣١﴾ وَٱلَّذِينَ هُمْ لِأَمَٰنَٰتِهِمْ وَعَهْدِهِمْ رَٰعُونَ ﴿٣٢﴾ وَٱلَّذِينَ هُم بِشَهَٰدَٰتِهِمْ قَآئِمُونَ ﴿٣٣﴾
وَٱلَّذِينَ هُمْ عَلَىٰ صَلَاتِهِمْ يُحَافِظُونَ ﴿٣٤﴾ أُو۟لَٰٓئِكَ فِى جَنَّٰتٍ مُّكْرَمُونَ ﴿٣٥﴾

19 ពិតប្រាកដណាស់មនុស្សលោកត្រូវបានគេបង្កើតឡើងដោយគ្មានការអត់ធ្មត់ឡើយ។
20 នៅពេលមានគ្រោះអាក្រក់កើតឡើង ចំពោះគេដូចជាឈឺឬខ្វះខាតពួកគេគ្មាន
ភាពអត់ធ្មត់។
21 តែនៅពេលដែលគេបានទទួលបានផលល្អដូចជាមានសុខមានទ្រព្យសម្បត្តិពួក

គេបែរផ្ងារិះកំណាញ់មិនបរិច្ចាគតាមមាគ៌ាអល់ឡោះ។
22 លើកលែងតែអ្នកដែលប្រតិបត្តិសឡាត។ពួកគេជ្រះស្អាត់ពីចរិកដ៏អាក្រក់នេះ។
23 ដែលពួកគេប្រកាន់ខ្ជាប់នឹងការប្រតិបត្តិសឡាតរបស់គេតាមពេលកំណត់ជានិច្ច គ្មានអ្វីធ្វើឱ្យគេរវល់ភ្លេចសឡាតនោះទេ។
24 នឹងបណ្តាអ្នកដែលដក់ទ្រព្យសម្បត្តិរបស់ពួកគេបរិច្ចាគតាមច្បាប់បានកំណត់។
25 ចែកជូនអ្នកក្រដែលចេះសុំគេនិងអ្នកក្រដែលមិនចេះសុំគេក្នុងចំណោមអ្នកខ្វះខាត់ដោយមូលហេតុអ្វីក៏ដោយ។
26 និងបណ្តាអ្នកដែលជឿជាក់លើថ្ងៃបរលោក។ជាថ្ងៃដែលអល់ឡោះតបស្នងទៅតាមអ្វីដែលគេសាកសម្បនឹងទទួលបាន។
27 នឹងបណ្តាអ្នកដែលកោតខ្លាចទារុណកម្មនៃម្ចាស់របស់ពួកគេ។ទោះបីជាពួកគេមានការប្រតិបត្តិអំពើល្អច្រើនក៏ដោយ។
28 ពិតណាស់ទារុណកម្មនៃម្ចាស់របស់ពួកគេគឺគួរឱ្យភ័យខ្លាចគ្មានអ្នកណាម្នាក់មានសុវត្ថិភាពឡើយ។
29 និងបណ្តាអ្នកដែលបានថែរក្សាប្រដាប់ភេទរបស់ពួកគេដោយការបឹទបាំងវានិងជៀសឆ្ងាយពីប្រការហ្សីណា។
30 លើកលែងតែចំពោះភរិយារបស់ពួកគេនិងខ្ញុំបម្រើស្រីដាច់ថ្លៃដែលនៅក្រោមការគ្រប់គ្រងរបស់ពួកគេប៉ុណ្ណោះ។ហើយពិតប្រាកដណាស់ពួកគេមិនត្រូវបានគេយកទោសពៃរ៍ឡើយក្នុងការរួមដំណេកជាមួយពួកនាង។
31 អ្នកណាហើយដែលបានស្វែងរកការត្រេកត្រអាលក្រៅពីអ្វីដែលបានរៀបរាប់អំពីប្រពន្ធនិងខ្ញុំបម្រើដាច់ថ្លៃនោះពួកទាំងនោះហើយគឺជាពួកដែលបានល្មើសនឹងបទបញ្ញត្តិរបស់អល់ឡោះ។
32 ហើយបណ្តាអ្នកដែលត្រូវបានគេផ្តល់ភាពស្មោះត្រង់ឱ្យថែរក្សាទ្រព្យសម្បត្តិកិច្ចការសម្ងាត់និងការសន្យារបស់ពួកគេ។គេមិនក្បត់នូវភាពស្មោះត្រង់ហើយគេមិនក្បត់សន្យាឡើយ។
33 ហើយបណ្តាអ្នកធ្វើសាក្សីដែលគោរពពាក្យសច្ចៈនិងយុត្តិធម៌សូម្បីចំពោះសាច់ញាតិមិនលាក់លៀម ឬមិនកែប្រែឡើយ។
34 ហើយបណ្តាអ្នកដែលថែរក្សាសឡាតរបស់ពួកគេ។ពួកគេបំពេញកាតព្វកិច្ចតាមពេលកំណត់ជានិច្ចហើយពួកគេមានភាពជ្រះស្អាត់និងមានចិត្តនឹងនរហើយពួកគេមិនដែលរវល់នឹងអ្វីមួយភ្លេចសឡាតឡើយ។
35 អ្នកដែលមានលក្ខណៈសម្បត្តិទាំងនោះហើយគឺជាអ្នកដែលត្រូវគេលើកតម្កើងនៅក្នុងឋានសួគ៌។ដោយទទួលបាននូវលាភសក្ការៈជានិរន្តនិងបានឃើញវង់ភក្ត្ររបស់អល់ឡោះដ៏មហាថ្កុំថ្កើង។

فَمَالِ ٱلَّذِينَ كَفَرُواْ قِبَلَكَ مُهۡطِعِينَ ﴿٣٦﴾ عَنِ ٱلۡيَمِينِ وَعَنِ ٱلشِّمَالِ عِزِينَ ﴿٣٧﴾ أَيَطۡمَعُ كُلُّ ٱمۡرِيٕٖ
مِّنۡهُمۡ أَن يُدۡخَلَ جَنَّةَ نَعِيمٖ ﴿٣٨﴾ كَلَّآۖ إِنَّا خَلَقۡنَٰهُم مِّمَّا يَعۡلَمُونَ ﴿٣٩﴾ فَلَآ أُقۡسِمُ بِرَبِّ ٱلۡمَشَٰرِقِ وَٱلۡمَغَٰرِبِ
إِنَّا لَقَٰدِرُونَ ﴿٤٠﴾ عَلَىٰٓ أَن نُّبَدِّلَ خَيۡرٗا مِّنۡهُمۡ وَمَا نَحۡنُ بِمَسۡبُوقِينَ ﴿٤١﴾ فَذَرۡهُمۡ يَخُوضُواْ وَيَلۡعَبُواْ
حَتَّىٰ يُلَٰقُواْ يَوۡمَهُمُ ٱلَّذِي يُوعَدُونَ ﴿٤٢﴾ يَوۡمَ يَخۡرُجُونَ مِنَ ٱلۡأَجۡدَاثِ سِرَاعٗا كَأَنَّهُمۡ إِلَىٰ نُصُبٖ
يُوفِضُونَ ﴿٤٣﴾ خَٰشِعَةً أَبۡصَٰرُهُمۡ تَرۡهَقُهُمۡ ذِلَّةٞۚ ذَٰلِكَ ٱلۡيَوۡمُ ٱلَّذِي كَانُواْ يُوعَدُونَ ﴿٤٤﴾

36 ហេតុអ្វីបានជាពួកអ្នកគ្មានជំនឿប្រញាប់បដិសេធចំពោះអ្នកលឿនយ៉ាងនេះ?
37 ពួកគេស្ថិតនៅជុំវិញអ្នកទាំងខាងស្តាំនិងខាងឆ្វេងជាក្រុមៗ។





38 តើរាល់ៗបុគ្គលក្នុងចំណោមពួកគេមានបំណងចង់ឱ្យអល់ឡោះបញ្ចូលគេចូលឋានសួគ៌ណាអ៊ីមឬ?ដើម្បីទទួលបានលាភសក្ការៈដែលឋិតថេរដោយពួកគេស្ថិតក្នុងភាពគ្មានជំនឿបែបនេះឬ?
39 មិនដូច្នោះទេ!ពិតណាស់យើងបានបង្កើតពួកគេពីទឹកកាមដែលទន់ខ្សោយពួកគេគ្មានលទ្ធភាពផ្តល់សំណាងល្អឬអាក្រក់ដល់ខ្លួនគេឡើយ។ហេតុអ្វីបានជាពួកគេក្រអឺតក្រទមបែបនេះ?
40 យើងស្បថនឹងម្ចាស់គ្រប់គ្រងកន្លែងដែលព្រះអាទិត្យនិងព្រះច័ន្ទរះនិងលិចថា៖ពិតប្រាកដណាស់យើងគឺជាព្រះដ៏មានអនុភាពខ្លាំងក្លាបំផុត។
41 លើការជំនួសពួកគេនឹងក្រុមផ្សេងដែលប្រតិបត្តិតាមអល់ឡោះហើយបំផ្លាញពួកគេចោល។គ្មានអ្វីដែលមិនធ្វើបាននោះទេ។ហើយបើសិនជាយើងចង់ធ្វើដូច្នោះគ្មាននរណាផ្ទាញនិងរារាំងយើងបានឡើយ។
42 ចូរអ្នក(មូហាំម៉ាត់)ទុកឱ្យពួកគេលិចលង់ក្នុងផ្លូវខុសនិងវង្វេងរបស់ពួកគេចុះ។និងឱ្យពួកគេលេងសើចរហូតដល់ពួកគេជួបនឹងថ្ងៃបរលោកជាថ្ងៃដែលត្រូវបានគេសន្យានៅក្នុងគម្ពីរគួរអាន។
43 ថ្ងៃដែលពួកគេងើបចេញពីផ្នូរយ៉ាងលឿនហាក់ដូចជាពួកគេប្រដេញគ្នាទៅកាន់កន្លែងលើកទង់។
44 ខ្សែភ្នែករបស់ពួកគេទន់ទាបមិនហ៊ានងើបមុខសម្លឹងមើលទេ។ខណៈដែលការល្អិតប្រាកគ្របដណ្តប់ពួកគេ។នោះគឺជាថ្ងៃដែលពួកគេត្រូវបានគេសន្យានៅលើលោកិយតែពួកគេចាប់អារម្មណ៍ឡើយ។

## នូហ

**គោលបំណងនៃស៊ូរោះ**

ភាពអត់ធ្មត់របស់អ្នកអំពាវនាវនិងការពោះពារក្នុងការអំពាវនាវ។ក្នុងសាចរឿងរបស់ណាពីនូហបានផ្តល់នូវភាពនឹងនរដល់អ្នកមានជំនឿនិងការគំរាមដល់អ្នកបដិសេធ។

**តាហ្វសៀរ**

إِنَّآ أَرۡسَلۡنَا نُوحًا إِلَىٰ قَوۡمِهِۦٓ أَنۡ أَنذِرۡ قَوۡمَكَ مِن قَبۡلِ أَن يَأۡتِيَهُمۡ عَذَابٌ أَلِيمٞ ١ قَالَ
يَٰقَوۡمِ إِنِّي لَكُمۡ نَذِيرٞ مُّبِينٌ ٢ أَنِ ٱعۡبُدُواْ ٱللَّهَ وَٱتَّقُوهُ وَأَطِيعُونِ ٣ يَغۡفِرۡ لَكُم مِّن
ذُنُوبِكُمۡ وَيُؤَخِّرۡكُمۡ إِلَىٰٓ أَجَلٖ مُّسَمًّىۚ إِنَّ أَجَلَ ٱللَّهِ إِذَا جَآءَ لَا يُؤَخَّرُۚ لَوۡ كُنتُمۡ تَعۡلَمُونَ ٤

1 ពិតប្រាកដណាស់យើងបានបញ្ជូននូហទៅកាន់ក្រុមរបស់គេឱ្យគេដាស់តឿនព្រមានក្រុមរបស់គេមុននឹងទារុណកម្មដ៏ឈឺចាប់ធ្លាក់មកលើពួកគេដោយសារពួកគេស៊ីរិកនឹងអល់ឡោះ។
2 ណាពីនូហបានពោលទៅកាន់ក្រុមរបស់គាត់ថា៖ឱក្រុមរបស់ខ្ញុំ!ពិតប្រាកដណាស់ខ្ញុំជាអ្នកដាស់តឿនព្រមានអំពីទារុណកម្មដ៏ពិតប្រាកដសម្រាប់ពួកអ្នកចូរពួកអ្នកទទួលសារភាពកុំហួសទៅចំពោះអល់ឡោះចុះ។
3 ហើយគោលបំណងនៃការដាស់តឿនរបស់ខ្ញុំទៅចំពោះពួកអ្នកគឺចូរពួកអ្នកគោរពសក្ការៈចំពោះអល់ឡោះតែមួយគត់និងមិនត្រូវធ្វើស្ហ៊ីរិកនឹងទ្រង់ឡើយហើយចូរកោតខ្លាចទ្រង់ដោយអនុវត្តតាមបទបញ្ជារបស់ទ្រង់និងជៀសវៀងពីប្រការដែលទ្រង់ហាមឃាត់ហើយនិងប្រតិបត្តិតាមខ្ញុំ។
4 ប្រសិនបើពួកអ្នកធ្វើដូច្នេះទ្រង់នឹងអភ័យទោសនូវបាបកម្មរបស់ពួកអ្នកហើយទ្រង់នឹងពន្យារអាយុជីវិតរបស់ពួកអ្នករហូតដល់ដំណាក់កាលចុងក្រោយបំផុតដែលអល់

ទ្បោះបានកំណត់សម្រាប់ពួកអ្នកនិងគ្រប់គ្រងផែនដីបានយូរ។ពិតប្រាកដណាស់ ការ
កំណត់របស់អល់ទ្បោះកាលណាវាមកដល់គឺគេមិនពន្យារពេលឡើយ។បើសិនជាពួក
អ្នកដឹងពួកអ្នកនឹងស្រវាន់ប្រញាប់ទៅរកជំនឿចំពោះអល់ទ្បោះនិងទទួលស ភាពកុំហុ
សពីអ្វីដែលពួកអ្នកកំពុងធ្វើអំពីប្រការស៊ីរិកនិងភាពវង្វេង។

قَالَ رَبِّ إِنِّي دَعَوْتُ قَوْمِي لَيْلًا وَنَهَارًا ﴿٥﴾ فَلَمْ يَزِدْهُمْ دُعَآءِيٓ إِلَّا فِرَارًا ﴿٦﴾ وَإِنِّي كُلَّمَا
دَعَوْتُهُمْ لِتَغْفِرَ لَهُمْ جَعَلُوٓاْ أَصَٰبِعَهُمْ فِيٓ ءَاذَانِهِمْ وَٱسْتَغْشَوْاْ ثِيَابَهُمْ وَأَصَرُّواْ
وَٱسْتَكْبَرُواْ ٱسْتِكْبَارًا ﴿٧﴾ ثُمَّ إِنِّي دَعَوْتُهُمْ جِهَارًا ﴿٨﴾ ثُمَّ إِنِّيٓ أَعْلَنتُ لَهُمْ وَأَسْرَرْتُ
لَهُمْ إِسْرَارًا ﴿٩﴾ فَقُلْتُ ٱسْتَغْفِرُواْ رَبَّكُمْ إِنَّهُۥ كَانَ غَفَّارًا ﴿١٠﴾ يُرْسِلِ ٱلسَّمَآءَ عَلَيْكُم
مِّدْرَارًا ﴿١١﴾ وَيُمْدِدْكُم بِأَمْوَٰلٍ وَبَنِينَ وَيَجْعَل لَّكُمْ جَنَّٰتٍ وَيَجْعَل لَّكُمْ أَنْهَٰرًا ﴿١٢﴾
مَّا لَكُمْ لَا تَرْجُونَ لِلَّهِ وَقَارًا ﴿١٣﴾ وَقَدْ خَلَقَكُمْ أَطْوَارًا ﴿١٤﴾ أَلَمْ تَرَوْاْ كَيْفَ خَلَقَ ٱللَّهُ سَبْعَ
سَمَٰوَٰتٍ طِبَاقًا ﴿١٥﴾ وَجَعَلَ ٱلْقَمَرَ فِيهِنَّ نُورًا وَجَعَلَ ٱلشَّمْسَ سِرَاجًا ﴿١٦﴾
وَٱللَّهُ أَنۢبَتَكُم مِّنَ ٱلْأَرْضِ نَبَاتًا ﴿١٧﴾ ثُمَّ يُعِيدُكُمْ فِيهَا وَيُخْرِجُكُمْ إِخْرَاجًا ﴿١٨﴾
وَٱللَّهُ جَعَلَ لَكُمُ ٱلْأَرْضَ بِسَاطًا ﴿١٩﴾ لِّتَسْلُكُواْ مِنْهَا سُبُلًا فِجَاجًا ﴿٢٠﴾

(5) ណាពីនូហបានពោលថា៖ឱម្ចាស់របស់ខ្ញុំ!ពិតប្រាកដណាស់ខ្ញុំបានអំពាវនាវក្រុម
របស់ខ្ញុំឱ្យគោរពសក្ការៈនិងមានជំនឿចំពោះទ្រង់តែមួយគត់ទាំងយប់ទាំងថ្ងៃ។
(6) តែការអំពាវនាវរបស់ខ្ញុំគ្មានកើនចម្រើនចំពោះពួកគេក្រៅពីការរត់គេចនិងងាក
ចេញកាន់តែឆ្ងាយពីអ្វីដែលខ្ញុំអំពាវនាវពួកគេឡើយ។
(7) ពិតប្រាដកណាស់រាល់ពេលដែលខ្ញុំអំពាវនាវពួកគេទៅរកការអភ័យទោសរបស់
ទ្រង់ដល់ពួកគេដូចជាការគោរពសក្ការៈទៅចំពោះទ្រង់តែមួយគត់ការអនុវត្តតាមទ្រង់
និងតាមអ្នកនាំសាររបស់ទ្រង់ពួកគេបែរជាយកម្រាមដៃរបស់ពួកគេញកត្រចៀក
របស់ពួកគេដើម្បីកុំឱ្យលឺអ្វីដែលខ្ញុំបានអំពាវនាវនិងយកសំលៀកបំពាក់របស់ពួកគេ
គ្របលើមុខកុំឱ្យឃើញខ្ញុំហើយថែមទាំងបានបន្តការប្រឆាំងនិងក្រអឺតក្រទមយ៉ាង
ខ្លាំងទៀតផង។
(8) បន្ទាប់មកខ្ញុំបានអំពាវនាវពួកគេដោយបើកចំហ។
(9) ក្រោយមកខ្ញុំពិតជាបានអំពាវនាវពួកគេដោយសំលេងខ្លាំងៗនិងជួនកាលខ្ញុំ
អំពាវនាវពួកគេដោយស្ងាត់ៗ។ប្រើវិធីសាស្ត្រគ្រប់បែបយ៉ាង។
(10) ហើយខ្ញុំបានពោលទៅកាន់ពួកគេថា៖ចូរពួកអ្នកសុំអភ័យទោសពីម្ចាស់របស់ពួក
អ្នកដោយការទទួលសារភាពកុំហុសចុះ។ពិតប្រាកដណាស់ទ្រង់មហាអភ័យទោស
បំផុតចំពោះអ្នកដែលទទួលសារភាពកុំហុស។
(11) ពិតណាស់ប្រសិនបើពួកអ្នកធ្វើដូច្នេះអល់ទ្បោះនឹងបញ្ចុះទឹកភ្លៀងជាច្រើន
សន្ធឹកសន្ធាប់តាមតម្រូវការពួកអ្នក។ហើយពួកអ្នកនឹងមិនជួបការរាំងស្ងួតឡើយ។
(12) ហើយទ្រង់នឹងបន្ថែមទ្រព្យសម្បត្តិនិងកូនចៅជាច្រើនដល់ពួកអ្នកនិងប្រទានចំការ
ដំណាំជាច្រើនឱ្យពួកអ្នកដើម្បីទទួលទានផ្លែផ្ការបស់វាហើយក៏ប្រទានទន្លេជាច្រើនឱ្យ
ពួកអ្នកដើម្បីបរិភោគនឹងស្រោចដំណាំនិងសត្វពាហនៈរបស់ពួកអ្នកផងដែរ។
(13) ហេតុអ្វីបានជាពួកអ្នកមិនខ្លាចចំពោះឧត្តមភាពរបស់ទ្រង់?
(14) ពិតណាស់ទ្រង់បានបង្កើតពួកអ្នកក្នុងដំណាក់កាលជាច្រើន។ពីទឹកកាមទៅជាដុំ



ឈាមហើយទៅជាដុំសាច់។
15 តើអ្នកមិនបានឃើញទេថាតើអល់ឡោះបានបង្កើតមេឃប្រាំពីរជាន់តំរៀបលើគ្នា
យ៉ាងដូចម្ដេច?
16 ហើយទ្រង់បង្កើតព្រះចន្ទនៅលើមេឃលោកីយ៍នេះមានពន្លឺសម្រាប់អ្នកនៅភព
ផែនដីហើយទ្រង់បង្កើតព្រះអាទិត្យជាចង្កៀងបំភ្លឺ។
17 ពិតណាស់អល់ឡោះបានបង្កើតធាតុដើមរបស់ពួកអ្នកអំពីដីដោយបង្កើតឪពុក
របស់អ្នកអាដាំអំពីដី។ក្រោយមកពួកអ្នកបរិភោគពីអ្វីដែលដុះចេញពីវា។
18 បន្ទាប់មកទ្រង់ធ្វើឱ្យពួកអ្នកវិលត្រឡប់ទៅក្នុងដីបន្ទាប់ពីស្លាប់។បន្ទាប់មកទ្រង់
នឹងឱ្យពួកអ្នកចេញពីក្នុងដីមកវិញ។
19 ហើយអល់ឡោះបានបង្កើតផែនដីជាកម្រាលសម្រាប់ពួកអ្នករស់នៅ។
20 សង្ឃឹមថាពួកអ្នកអាចធ្វើដំណើរលើវាតាមផ្លូវជាច្រើនដែលទូលំទូលាយដើម្បី
ទទួលផលដែលត្រឹមត្រូវ។

قَالَ نُوحٌ رَّبِّ إِنَّهُمْ عَصَوْنِي وَاتَّبَعُوا مَن لَّمْ يَزِدْهُ مَالُهُ وَوَلَدُهُ إِلَّا خَسَارًا ﴿٢١﴾
وَمَكَرُوا مَكْرًا كُبَّارًا ﴿٢٢﴾ وَقَالُوا لَا تَذَرُنَّ آلِهَتَكُمْ وَلَا تَذَرُنَّ وَدًّا وَلَا سُوَاعًا وَلَا يَغُوثَ
وَيَعُوقَ وَنَسْرًا ﴿٢٣﴾ وَقَدْ أَضَلُّوا كَثِيرًا وَلَا تَزِدِ الظَّالِمِينَ إِلَّا ضَلَالًا

21 ណូហ៍ពីនូហបានពោលថា៖ឱម្ចាស់របស់ខ្ញុំ!ពិតប្រាកដណាស់ពួកគេបានប្រឆាំង
នឹងខ្ញុំលើអ្វីដែលទ្រង់ប្រើខ្ញុំអំពីការមានជំនឿនិងគោរពសក្ការៈចំពោះទ្រង់តែមួយគ
ត់។ហើយថែមទាំងបានធ្វើតាមមេដឹកនាំរបស់ពួកគេដែលទទួលបានលាភសក្ការៈជា
ច្រើនអំពីទ្រព្យសម្បត្តិនិងកូនចៅរបស់គេ។តែលាភសក្ការៈនោះមិនបានបន្ថែមអ្វីដល់
ពួកគេឡើយក្រៅពីភាពវង្វេង។
22 ពួកគេប្រើល្បិចកលយ៉ាងធំដុំគឺចាក់រុកមនុស្សវណ្ណៈតូចទាបឱ្យបំផ្លាញណូពីនូស។
23 ពួកគេបាននិយាយទៅកាន់ពួកអ្នកដើរតាមខ្លួនថា៖ចូរពួកអ្នកកុំបោះបង់ចោល
ការគោរពសក្ការៈចំពោះព្រះៗរបស់ពួកអ្នកនិងកុំបោះបង់ចោលការគោរពសក្ការៈ
ចំពោះរូបបដិមាព្រះវ៉ាដនឹងស៊ូវ៉ាកនិងយ៉ាហ៊ូសនឹងយ៉ាអ៊ូកនិងណាសរ៍ឱ្យសោះ។
24 ហើយជាការពិតណាស់ព្រះទាំងនោះបានធ្វើឱ្យមនុស្សជាច្រើនវង្វេង។សូមទ្រង់
មេត្តាកុំបន្ថែមអ្វីដល់ពួកដែលបំពានក្រៅពីភាពវង្វេងអំពីការពិត។

مِّمَّا خَطِيئَاتِهِمْ أُغْرِقُوا فَأُدْخِلُوا نَارًا فَلَمْ يَجِدُوا لَهُم مِّن دُونِ اللَّهِ أَنصَارًا ﴿٢٥﴾
وَقَالَ نُوحٌ رَّبِّ لَا تَذَرْ عَلَى الْأَرْضِ مِنَ الْكَافِرِينَ دَيَّارًا ﴿٢٦﴾ إِنَّكَ إِن تَذَرْهُمْ يُضِلُّوا
عِبَادَكَ وَلَا يَلِدُوا إِلَّا فَاجِرًا كَفَّارًا ﴿٢٧﴾ رَّبِّ اغْفِرْ لِي وَلِوَالِدَيَّ وَلِمَن دَخَلَ بَيْتِيَ
مُؤْمِنًا وَلِلْمُؤْمِنِينَ وَالْمُؤْمِنَاتِ وَلَا تَزِدِ الظَّالِمِينَ إِلَّا تَبَارًا

25 ដោយសារកំហុសរបស់ពួកគេដែលបានប្រព្រឹត្តពួកគេត្រូវបានលិចលង់ដោយទឹកជំនន់
នៅលើលោកិយ៍។បន្ទាប់ពីនោះគេបួញលពួកគេទៅក្នុងឋាននរកភ្លាមៗ។ហើយគ្មាននរណា
អាចជួយពួកគេក្រៅពីអល់ឡោះឡើយក្នុងការលិចលង់ក្នុងទឹកនិងភ្លើងនរក។
26 ណូពីនូហបានពោលបន្ទាប់ពីអល់ឡោះបានប្រាប់ថាក្រុមរបស់អ្នកលែងមាន
ជំនឿទៀតហើយលើកលែងតែអ្នកដែលមានជំនឿរួចប៉ុណ្ណោះថា៖ឱម្ចាស់របស់ខ្ញុំ!
សូមទ្រង់មេត្តាកុំទុកឱ្យពួកគ្មានជំនឿណាម្នាក់រស់នៅលើផែនដីនេះ។
27 បើសិនជាទ្រង់ទុកឱ្យពួកគេរស់ពួកគេនឹងធ្វើឱ្យអ្នកដែលមានជំនឿចំពោះទ្រង់វ
ង្វេង។ពួកគេគ្មានបង្កើតកូនក្រៅពីកូនដែលអាក្រក់បោះបងការគោរពប្រតិបត្តិចំពោះ




ទ្រង់។និងមិនថ្លែងអំណរគុណចំពោះលាភសក្ការៈរបស់ទ្រង់។
28 ឱម្ចាស់របស់ខ្ញុំ!សូមទ្រង់មេត្តាអភ័យទោសដល់ខ្ញុំ និងឪពុកម្ដាយរបស់ខ្ញុំនិងអ្នកដែលបានចូលក្នុងផ្ទះរបស់ខ្ញុំដោយមានជំនឿនិងបណ្ដាអ្នកដែលមានជំនឿប្រុសស្រីផងៗហើយសូមទ្រង់មេត្តាកុំបន្ថែមអ្វីដល់ពួកដែលបំពានក្រៅពីភាពវិនាសនិងខាតបង់។

# អាល់ជិន

**គោលបំណងនៃសូរ៉ោះ:** ការបញ្ជាក់យ៉ាងពិតប្រាកដពីការបញ្ចុះគម្ពីគួរអាន ហើយពិតណាស់វាមកពីអល់ឡោះ។និងការមានជំនឿរបស់ជិននឹងវាហើយនិងច្រានចោលនូវការអះអាងមិនពិតរបស់ពួកគ្មានជំនឿ។

**តាហ្វសៀរ**

قُلۡ أُوحِيَ إِلَيَّ أَنَّهُ ٱسۡتَمَعَ نَفَرٞ مِّنَ ٱلۡجِنِّ فَقَالُوٓاْ إِنَّا سَمِعۡنَا قُرۡءَانًا عَجَبٗا ١
يَهۡدِيٓ إِلَى ٱلرُّشۡدِ فَـَٔامَنَّا بِهِۦۖ وَلَن نُّشۡرِكَ بِرَبِّنَآ أَحَدٗا ٢ وَأَنَّهُۥ تَعَٰلَىٰ جَدُّ رَبِّنَا مَا ٱتَّخَذَ
صَٰحِبَةٗ وَلَا وَلَدٗا ٣ وَأَنَّهُۥ كَانَ يَقُولُ سَفِيهُنَا عَلَى ٱللَّهِ شَطَطٗا ٤ وَأَنَّا ظَنَنَّآ أَن لَّن
تَقُولَ ٱلۡإِنسُ وَٱلۡجِنُّ عَلَى ٱللَّهِ كَذِبٗا ٥ وَأَنَّهُۥ كَانَ رِجَالٞ مِّنَ ٱلۡإِنسِ يَعُوذُونَ بِرِجَالٖ مِّنَ ٱلۡجِنِّ
فَزَادُوهُمۡ رَهَقٗا ٦ وَأَنَّهُمۡ ظَنُّواْ كَمَا ظَنَنتُمۡ أَن لَّن يَبۡعَثَ ٱللَّهُ أَحَدٗا ٧

1 ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់ក្រុមរបស់អ្នកថាៈខ្ញុំត្រូវបានអល់ឡោះផ្ដល់វ៉ាហ៊ីឱ្យដឹងថាពិតប្រាកដណាស់មានជិនមួយក្រុមនៅក្នុងចំការល្មើបានស្ដាប់ខ្ញុំសូត្រគម្ពីរគួរអាន។នៅពេលពួកគេត្រលប់ទៅកាន់ក្រុមរបស់ខ្លួនវិញពួកគេបាននិយាយប្រាប់គ្នាថាៈពិតប្រាកដណាស់ពួកយើងបានស្ដាប់ការសូត្រគម្ពីរគួរអានមួយដ៏អស្ចារ្យទាំងពាក្យពេចន៍និងវោហារសាស្ដ្រ។
2 ហើយគួរអានដែលយើងបានស្ដាប់លឺនេះវាចង្អុលបង្ហាញទៅរកមាគ៌ាដ៏ត្រឹមត្រូវទាំងគោលជំនឿពាក្យសំដីនិងទង្វើ។ហើយពួកយើងក៏មានជំនឿលើវា។ហើយពួកយើងមិនគោរពសក្ការៈចំពោះអ្នកណាម្នាក់រួមជាមួយម្ចាស់របស់ពួកយើងដែលបានបញ្ចុះវាឡើយ។
3 ហើយក៏ជឿថាអានុភាពនៃម្ចាស់របស់យើងមហាឧត្ដុង្គឧត្ដមខ្ពង់ខ្ពស់។ទ្រង់គ្មានភរិយានិងគ្មានបុត្រដូចអ្វីដែលពួកគ្មានជំនឿនិយាយឡើយ។
4 ហើយពិតប្រាកដណាស់អ៊ីព្លីសធ្លាប់និយាយចោទប្រកាន់ចំពោះអល់ឡោះនូវពាក្យសំដីហួសហេតុដូចជាអះអាងថាទ្រង់មានភរិយានិងបុត្រ។
5 ហើយពិតប្រាកដណាស់ពួកយើងបានគិតថាពួកអ្នកគ្មានជំនឿអំពីមនុស្សលោកនិងជិននឹងមិននិយាយនូវពាក្យសំដីភូតកុហកឡើយខណ្ឌៈដែលពួកគេអះអាងថាទ្រង់មានដៃគូនិងបុត្រហើយពួកយើងក៏ជឿតាមពាក្យសំដីពួកគេ។
6 ហើយពិតប្រាកដណាស់នៅសម័យជាហ៊ីលីយ៉ះមានបុរសនៃមនុស្សលោកបានសុំពីបុរសជិនឱ្យការពារពួកគេនៅពេលដែលពួកគេស្ថិតក្នុងទីតាំងគួឱ្យខ្លាចហើយម្នាក់ក្នុងចំណោមពួកគេបាននិយាយថាៈសូមអ្នកតាម្ចាស់ជ្រលងភ្នំបញ្ចៀសខ្ញុំពីអំពើអាក្រក់របស់កូនចៅអ្នកតាផងចុះ។ប៉ុន្ដែជិនទាំងនោះរឹតតែបន្ថែមភាពភ័យខ្លាចដល់ពួកគេថែមទៀត។
7 ហើយពិតប្រាកដណាស់ពួកគេមនុស្សបានគិត ដូចដែលពួកអ្នក(ជិនគ្មានជំនឿ)បានគិតដែរថា អល់ឡោះនឹងមិនធ្វើឱ្យអ្នកណាម្នាក់រស់ឡើងវិញម្ដងទៀតបន្ទាប់ពីពួកគេបានស្លាប់ដើម្បីមកកាត់ក្ដីឡើយ។





وَأَنَّا لَمَسْنَا ٱلسَّمَآءَ فَوَجَدْنَٰهَا مُلِئَتْ حَرَسًا شَدِيدًا وَشُهُبًا ﴿٨﴾ وَأَنَّا كُنَّا نَقْعُدُ مِنْهَا
مَقَٰعِدَ لِلسَّمْعِ ۖ فَمَن يَسْتَمِعِ ٱلْـَٔانَ يَجِدْ لَهُۥ شِهَابًا رَّصَدًا ﴿٩﴾ وَأَنَّا لَا نَدْرِىٓ أَشَرٌّ
أُرِيدَ بِمَن فِى ٱلْأَرْضِ أَمْ أَرَادَ بِهِمْ رَبُّهُمْ رَشَدًا ﴿١٠﴾ وَأَنَّا مِنَّا ٱلصَّٰلِحُونَ وَمِنَّا دُونَ ذَٰلِكَ ۖ كُنَّا
طَرَآئِقَ قِدَدًا ﴿١١﴾ وَأَنَّا ظَنَنَّآ أَن لَّن نُّعْجِزَ ٱللَّهَ فِى ٱلْأَرْضِ وَلَن نُّعْجِزَهُۥ هَرَبًا ﴿١٢﴾ وَأَنَّا
لَمَّا سَمِعْنَا ٱلْهُدَىٰٓ ءَامَنَّا بِهِۦ ۖ فَمَن يُؤْمِنۢ بِرَبِّهِۦ فَلَا يَخَافُ بَخْسًا وَلَا رَهَقًا ﴿١٣﴾ وَأَنَّا
مِنَّا ٱلْمُسْلِمُونَ وَمِنَّا ٱلْقَٰسِطُونَ ۖ فَمَنْ أَسْلَمَ فَأُو۟لَٰٓئِكَ تَحَرَّوْا۟ رَشَدًا ﴿١٤﴾ وَأَمَّا
ٱلْقَٰسِطُونَ فَكَانُوا۟ لِجَهَنَّمَ حَطَبًا ﴿١٥﴾ وَأَلَّوِ ٱسْتَقَٰمُوا۟ عَلَى ٱلطَّرِيقَةِ لَأَسْقَيْنَٰهُم مَّآءً غَدَقًا
لِّنَفْتِنَهُمْ فِيهِ ۚ وَمَن يُعْرِضْ عَن ذِكْرِ رَبِّهِۦ يَسْلُكْهُ عَذَابًا صَعَدًا ﴿١٦﴾

(8) ហើយពិតប្រាកដណាស់ពួកយើង(ជិន)បានព្យាយាមឡើងទៅលើមេឃដើម្បីស្តាប់រឿងអាថ៌កំបាំង។ រួចយើងបានជួបប្រទះនៅទីនោះពោរពេញទៅដោយអ្នកការពារដ៏រឹងមាំអំពីម៉ាឡាអ៊ីកាត់ការពារពីការមកលួចស្តាប់ដំណឹងនិងមានផ្កាយដាច្រើនសម្រាប់បាញ់ពួកអ្នកដែលទៅជិតមេឃ។

(9) ពួកយើងពីមុនធ្លាប់អង្គុយនៅកន្លែងមួយនៅលើមេឃដើម្បីលួចស្តាប់ដំណឹងពីម៉ាឡាអ៊ីកាត់រួចយកដំណឹងនោះមកប្រាប់គ្រូទាយនៅលើផែនដី។ តែពេលឥឡូវនេះកិច្ចការបានប្រែប្រួល នរណាម្នាក់ទៅលួចស្តាប់នឹងត្រូវទទួលរងនូវការបាញ់ប្រហារដោយអាចម៍ផ្កាយ។

(10) ដោយសារតែការការពារនេះទើបពួកយើងមិនដឹងថាតើអល់ឡោះចង់ធ្វើទារុណកម្មអ្នកដែលនៅលើផែនដីឬមួយក៏ម្ចាស់របស់គេចង់ចង្អុលបង្ហាញមាគ៌ាត្រឹមត្រូវដល់ពួកគេ? ពិតដំណឹងនៅលើមេឃត្រូវបានកាត់ផ្តាច់ពីពួកយើង។

(11) ហើយពិតប្រាកដណាស់ក្នុងចំណោមពួកយើង(ជិន)មានអ្នកខ្លះជាអ្នកដែលសាងអំពើល្អត្រឹមត្រូវនិងមានអ្នកខ្លះទៀតមិនមែនជាអ្នកមានជំនឿនឹងអាក្រក់។ ហើយពួកយើងមានមាគ៌ាខុសៗគ្នានិងផ្នត់គំនិតផ្សេងៗគ្នា។

(12) ពួកយើងបានដឹងយ៉ាងច្បាស់ថាបើសិនជាអល់ឡោះសព្វព្រះទ័យចង់ឱ្យរឿងអ្វីមួយកើតឡើងចំពោះពួកយើងគឺពួកយើងមិនអាចរំលងហួសពីការកំណត់របស់ទ្រង់ឡើយ។ ពួកយើងមិនអាចគេចរួចពីទ្រង់ជាដាច់ខាត។

(13) ហើយពិតប្រាកដណាស់នៅពេលដែលពួកយើងបានស្តាប់នូវការចង្អុលបង្ហាញពីគម្ពីរគួរអានពួកយើងក៏មានជំនឿលើវា។ អ្នកណាហើយដែលជឿលើម្ចាស់របស់គេគឺគេមិនខ្លាចខ្វះផលបុណ្យហើយក៏មិនខ្លាចគេបន្ថែមបាបកម្មដែរ។

(14) ហើយពិតប្រាកដណាស់នៅក្នុងចំណោមពួកយើងមានអ្នកខ្លះជាមូស្លីមគោរពតាមអល់ឡោះនិងអ្នកខ្លះទៀតជាអ្នកល្មើសបំពានងាកចេញពីផ្លូវត្រូវ។ អ្នកណាហើយដែលបានប្រតិបត្តិតាមអល់ឡោះនិងធ្វើអំពើកុសលអ្នកទាំងនោះជាអ្នកដែលមានបំណងទៅរកការចង្អុលបង្ហាញនិងមាគ៌ាដ៏ត្រឹមត្រូវ។

(15) រីឯពួកអ្នកដែលល្មើសឈ្លានពានងាកចេញពីផ្លូវត្រូវគឺពួកគេនឹងជាក្លាយជាអុសសម្រាប់បង្កាត់ភ្លើងនរក៏ ដូចគេយកមនុស្សធ្វើជាអុសដែរ។

(16) ខ្ញុំត្រូវបានគេផ្តល់វាហើយឱ្យដឹងថាប្រសិនបើពួកមនុស្សលោកនិងជិនស្ថិតនៅលើមាគ៌ាដ៏ត្រឹមត្រូវនោះហើយអនុវត្តតាមវាអល់ឡោះពិតជានឹងផ្តល់ឱ្យពួកគេនូវទឹកភ្លៀងនិងផ្តល់លាភសក្ការៈយ៉ាងច្រើនសន្ធឹកសន្ធាប់។



17 ដើម្បីសាកល្បងពួកគេឱ្យដឹងថាតើពួកគេដឹងគុណយ៉ាងដូចម្ដេចចំពោះពរជ័យ
ទាំងនេះ?នរណាហើយងាកចេញពីគម្ពីគួរអានឬងាកចេញពីការទូន្មានគេនឹង
បញ្ចូលវាទៅក្នុងទារុណកម្មដ៏ធ្ងន់ធ្ងរនិងលំបាកជាទីបំផុត។

وَأَنَّ ٱلۡمَسَٰجِدَ لِلَّهِ فَلَا تَدۡعُواْ مَعَ ٱللَّهِ أَحَدٗا ﴿١٨﴾ وَأَنَّهُۥ لَمَّا قَامَ عَبۡدُ ٱللَّهِ يَدۡعُوهُ كَادُواْ
يَكُونُونَ عَلَيۡهِ لِبَدٗا ﴿١٩﴾ قُلۡ إِنَّمَآ أَدۡعُواْ رَبِّي وَلَآ أُشۡرِكُ بِهِۦٓ أَحَدٗا ﴿٢٠﴾ قُلۡ إِنِّي لَآ أَمۡلِكُ
لَكُمۡ ضَرّٗا وَلَا رَشَدٗا ﴿٢١﴾ قُلۡ إِنِّي لَن يُجِيرَنِي مِنَ ٱللَّهِ أَحَدٞ وَلَنۡ أَجِدَ مِن دُونِهِۦ مُلۡتَحَدًا
﴿٢٢﴾ إِلَّا بَلَٰغٗا مِّنَ ٱللَّهِ وَرِسَٰلَٰتِهِۦۚ وَمَن يَعۡصِ ٱللَّهَ وَرَسُولَهُۥ فَإِنَّ لَهُۥ نَارَ جَهَنَّمَ خَٰلِدِينَ
فِيهَآ أَبَدًا ﴿٢٣﴾ حَتَّىٰٓ إِذَا رَأَوۡاْ مَا يُوعَدُونَ فَسَيَعۡلَمُونَ مَنۡ أَضۡعَفُ نَاصِرٗا وَأَقَلُّ عَدَدٗا ﴿٢٤﴾

18 ពិតប្រាកដណាស់ម៉ាស្ជិតជាកន្លែងពិសេសសម្រាប់អល់ឡោះតែមួយគត់ពុំមែន
សម្រាប់អ្នកផ្សេងទេ។ចូរពួកអ្នកកុំបួងសួងសុំអ្នកណាម្នាក់រួមជាមួយអល់ឡោះឱ្យ
សោះ។នាំឱ្យដូចវិហាររបស់ពួកយូដានិងពួកគ្រឹស្ទាន។
19 ហើយពិតប្រាកដណាស់នៅពេលដែលខ្ញុំរបស់អល់ឡោះម្នាក់គឺមូហាំម៉ាត់បានក្រោក
ឈរឡើងដើម្បីថ្វាយបង្គំទៅចំពោះម្ចាស់របស់គាត់នៅក្នុងចំការល្មើពួកជិនមួយក្រុ
មស្ទើរតែប្រជ្រៀតគ្នាស្ទើរតែជាន់លើគ្នាទៅរកគេដើម្បីស្ដាប់គេសូត្រគម្ពីរគួរអាន។
20 ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់អ្នកគ្មានជំនឿថា៖ពិតប្រាកដណាស់ខ្ញុំគោរព
សក្ការៈចំពោះម្ចាស់របស់ខ្ញុំតែមួយគត់ហើយខ្ញុំមិនគោរពសក្ការៈអ្នកណាម្នាក់រួម
ជាមួយនឹងទ្រង់ឡើយ។
21 ចូរអ្នកពោលទៅកាន់ពួកគេថា៖ខ្ញុំគ្មានលទ្ធភាពការពារពួកអ្នកពីគ្រោះថ្នាក់ដែល
អល់ឡោះបានកំណត់មកលើពួកអ្នកឡើយហើយខ្ញុំក៏គ្មានលទ្ធភាពផ្ដល់ផល
ប្រយោជន៍ដល់ពួកអ្នកដែរនូវអ្វីដែលអល់ឡោះបានហាមឃាត់វាលើពួកអ្នក។
22 ចូរអ្នកពោលទៅកាន់ពួកគេថា៖គ្មានអ្នកណាម្នាក់អាចជួយសង្គ្រោះខ្ញុំឱ្យរួចផុតពី
ទារុណកម្មរបស់អល់ឡោះបានឡើយប្រសិនបើខ្ញុំប្រឆាំងនឹងទ្រង់ហើយខ្ញុំក៏គ្មាន
កន្លែងជ្រកកោនណាផ្សេងពីទ្រង់ដែរ។
23 ខ្ញុំគ្រាន់តែជាអ្នកផ្សព្វផ្សាយនូវអ្វីដែលអល់ឡោះប្រើឱ្យខ្ញុំផ្សព្វផ្សាយទៅកាន់ពួក
អ្នកតែប៉ុណ្ណោះ។អ្នកណាហើយប្រឆាំងនឹងអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់នោះ
ពិតប្រាកដណាស់សម្រាប់គេគឺនរក ជើហាន់ណាំដោយពួកគេស្ថិតនៅក្នុងនោះជា
អមតៈដោយគ្មានថ្ងៃចេញឡើយ។
24 ពួកគ្មានជំនឿនូវតែបន្តភាពគ្មានជំនឿរបស់ពួកគេរហូតដល់ពេលដែលពួកគេ
បានជួបថ្ងៃបរលោកហើយបានឃើញនូវទារុណកម្មដែលពួកគេត្រូវគេសន្យានៅលើ
លោកិយ។ខណៈពេលនោះពួកគេនឹងដឹងថាតើអ្នកណាមានជំនួយខ្សោយជាងគេនិង
មានបក្សពួកតិចជាងគេ?

قُلۡ إِنۡ أَدۡرِيٓ أَقَرِيبٞ مَّا تُوعَدُونَ أَمۡ يَجۡعَلُ لَهُۥ رَبِّيٓ أَمَدًا ﴿٢٥﴾ عَٰلِمُ ٱلۡغَيۡبِ فَلَا يُظۡهِرُ
عَلَىٰ غَيۡبِهِۦٓ أَحَدًا ﴿٢٦﴾ إِلَّا مَنِ ٱرۡتَضَىٰ مِن رَّسُولٖ فَإِنَّهُۥ يَسۡلُكُ مِنۢ بَيۡنِ يَدَيۡهِ
وَمِنۡ خَلۡفِهِۦ رَصَدٗا ﴿٢٧﴾ لِّيَعۡلَمَ أَن قَدۡ أَبۡلَغُواْ رِسَٰلَٰتِ رَبِّهِمۡ وَأَحَاطَ بِمَا لَدَيۡهِمۡ
وَأَحۡصَىٰ كُلَّ شَيۡءٍ عَدَدَۢا ﴿٢٨﴾

25 ចូរអ្នក(មូហាំម៉ាត់)ពោលទៅកាន់អ្នកគ្មានជំនឿដែលបដិសេធការរស់ឡើងវិញ





ថា៖ខ្ញុំមិនដឹងទេថាតើទារុណកម្មដែលគេសន្យាចំពោះពួកអ្នកនោះនឹងកើតឡើងក្នុងពេលឆាប់ៗនេះឬក៏ម្ចាស់របស់ខ្ញុំពន្យារពេលវាដោយគ្មាននរណាម្នាក់ដឹងឡើយលើកលែងតែអល់ឡោះមួយអង្គគត់?

(26) ទ្រង់ជាម្ចាស់ដែលដឹងនូវប្រការអាថ៌កំបាំងទាំងអស់គ្មានអ្វីអាចលាក់បាំងនឹងទ្រង់បានឡើយ។ហើយទ្រង់មិនលាតត្រដាងអាថ៌កំបាំងរបស់ទ្រង់ឱ្យនរណាម្នាក់ឃើញឡើយ។

(27) លើកលែងតែអ្នកណាដែលទ្រង់ជ្រើសរើសគេធ្វើជាអ្នកនាំសារប៉ុណ្ណោះ។ពិតណាស់គេអាចមើលបានតាមចិត្តប្រាថ្នាហើយទ្រង់បានចាត់តាំងម៉ាឡាអ៊ីកាត់ឃ្លាំមើលនៅខាងមុខនិងនៅខាងក្រោយរ៉សូលុលឡោះ។ពួកគេការពារគាត់ពីការបៀតបៀនរបស់ស្ហៃតនចំពោះអាថ៌កំបាំងដែលទ្រង់បានបង្ហាញប្រាប់គាត់។

(28) ដើម្បីទ្រង់ដឹងថាពួកគេពិតជាបានផ្សព្វផ្សាយសារនៃម្ចាស់របស់ពួកគេដែលទ្រង់បានប្រើឱ្យពួកគេផ្សព្វផ្សាយ។ទ្រង់ដឹងជ្រាបនូវអ្វីដែលពួកម៉ាឡាអ៊ីកាត់កំពុងឃ្លាំមើលឬអ្វីដែលរ៉ស៊ូលុលឡោះកំពុងតែផ្សព្វផ្សាយនឹងគ្រប់ស្ថានភាពទាំងអស់របស់ពួកគេហើយទ្រង់ដឹងចំនួនគ្រប់អ្វីៗទាំងអស់។

## អាល់មូសហ្សាំមិល

**គោលបំណងនៃស៊ូរ៉ោះ**

រំលឹកពីអាហារនៃវិញ្ញាណរបស់អ្នកអំពាវនាវក្នុងការជួបប្រទះឧបសគ្គនិងផលលំបាកក្នុងជីវិត។ការផ្តល់ភាពនឹងនរដល់ណាពីនិងព្រមានដល់អ្នកប្រឆាំងបដិសេធ។

**តាហ្វសៀរ**

يَٰٓأَيُّهَا ٱلۡمُزَّمِّلُ ١ قُمِ ٱلَّيۡلَ إِلَّا قَلِيلٗا ٢ نِّصۡفَهُۥٓ أَوِ ٱنقُصۡ مِنۡهُ قَلِيلًا ٣
أَوۡ زِدۡ عَلَيۡهِ وَرَتِّلِ ٱلۡقُرۡءَانَ تَرۡتِيلًا ٤ إِنَّا سَنُلۡقِي عَلَيۡكَ قَوۡلٗا ثَقِيلًا ٥ إِنَّ نَاشِئَةَ ٱلَّيۡلِ
هِيَ أَشَدُّ وَطۡـٔٗا وَأَقۡوَمُ قِيلًا ٦ إِنَّ لَكَ فِي ٱلنَّهَارِ سَبۡحٗا طَوِيلٗا ٧ وَٱذۡكُرِ ٱسۡمَ رَبِّكَ وَتَبَتَّلۡ
إِلَيۡهِ تَبۡتِيلٗا ٨ رَّبُّ ٱلۡمَشۡرِقِ وَٱلۡمَغۡرِبِ لَآ إِلَٰهَ إِلَّا هُوَ فَٱتَّخِذۡهُ وَكِيلٗا ٩

(1) ឱអ្នកដែលដណ្តប់ភួយ(គឺណាពីមូហាំម៉ាត់)។

(2) ចូរអ្នកក្រោកសឡាត់នៅពេលយប់លើកលែងតែ បន្តិចបន្តួចប៉ុណ្ណោះដើម្បីសម្រាក។

(3) ចូរអ្នកសឡាតពាក់កណ្តាលយប់បើអ្នកចង់ឬតិចជាងពាក់កណ្តាលបន្តិចរហូតដល់មួយភាគបី។

(4) ឬច្រើនជាងពាក់កណ្តាលយប់បន្តិចរហូតដល់ពីភាគបី។ហើយចូរអ្នកសូត្រគម្ពីរគួរអានមួយៗតាមសម្រួលនិងឱ្យច្បាស់លាស់។

(5) ពិតប្រាកដណាស់យើងនឹងបញ្ចុះឱ្យអ្នកនូវគម្ពីរគួរអានដ៏ឧត្តុង្គឧត្តមដែលមានច្បាប់ការតព្វកិច្ច(ហ្វារឌូ)ច្បាប់ព្រហ្មទណ្ឌច្បាប់ហាឡាលហារ៉ាមនិងសីលធម៌និងផ្សេងៗទៀត។

(6) ពិតប្រាកដណាស់ថេរវេលានៅពេលយប់គឺវាធ្វើឱ្យចិត្តមានភាពនឹងនរនិងធ្វើឱ្យការសូត្រគម្ពីរគួរអាន មានភាពត្រឹមត្រូវជាងពេលថ្ងៃ។

(7) ពិតណាស់នៅពេលថ្ងៃអ្នកបានចំណាយពេលច្រើនដើម្បីបំពេញតម្រូវការរបស់ខ្លួន។ដូច្នេះចូរក្រោកសឡាត់នៅពេលយប់។

(8) ហើយចូរអ្នករំលឹកទៅចំពោះអល់ឡោះដោយប្រភេទនៃការរំលឹកផ្សេងៗនិងត្រូវគោរពសក្ការៈចំពោះទ្រង់ដោយចិត្តស្មោះស។

9 អល់ឡោះជាម្ចាស់នៃទិសខាងកើតនិងទិសខាងលិចដែលគ្មានម្ចាស់ណាផ្សេង
ត្រូវគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ។ចូរអ្នកយកទ្រង់ធ្វើជាអ្នកគាំពារ
រាល់កិច្ចការរបស់អ្នកចុះ។

وَٱصۡبِرۡ عَلَىٰ مَا يَقُولُونَ وَٱهۡجُرۡهُمۡ هَجۡرٗا جَمِيلٗا ١٠ وَذَرۡنِي وَٱلۡمُكَذِّبِينَ أُوْلِي ٱلنَّعۡمَةِ
وَمَهِّلۡهُمۡ قَلِيلًا ١١ إِنَّ لَدَيۡنَآ أَنكَالٗا وَجَحِيمٗا ١٢ وَطَعَامٗا ذَا غُصَّةٖ وَعَذَابًا أَلِيمٗا ١٣
يَوۡمَ تَرۡجُفُ ٱلۡأَرۡضُ وَٱلۡجِبَالُ وَكَانَتِ ٱلۡجِبَالُ كَثِيبٗا مَّهِيلًا ١٤ إِنَّآ أَرۡسَلۡنَآ إِلَيۡكُمۡ رَسُولٗا شَٰهِدًا
عَلَيۡكُمۡ كَمَآ أَرۡسَلۡنَآ إِلَىٰ فِرۡعَوۡنَ رَسُولٗا ١٥ فَعَصَىٰ فِرۡعَوۡنُ ٱلرَّسُولَ فَأَخَذۡنَٰهُ أَخۡذٗا وَبِيلٗا ١٦
فَكَيۡفَ تَتَّقُونَ إِن كَفَرۡتُمۡ يَوۡمٗا يَجۡعَلُ ٱلۡوِلۡدَٰنَ شِيبًا ١٧
ٱلسَّمَآءُ مُنفَطِرُۢ بِهِۦۚ كَانَ وَعۡدُهُۥ مَفۡعُولًا ١٨

10 ចូរអត់ធ្មត់ចំពោះសម្ដីរបស់ពួកបដិសេធដូចជាការជេរប្រមាថការមើលងាយ។
និងត្រូវចាកចេញឱ្យឆ្ងាយពីពួកគេក្នុងលក្ខណៈមួយដ៏ល្អប្រពៃ។
11 ចូរកុំយកចិត្តទុកដាក់ជាមួយពួកដែលបដិសេធក្រុមដែលត្រេកត្រអាលនឹងការ
សប្បាយនៅលើលោកិយ។ចូរទុកពួកគេឱ្យយើងនិងទុកពេលឱ្យពួកគេបន្តិចសិនចុះ
រហូតដល់ពេលកំណត់របស់ពួកគេ។
12 ពិតប្រាកដណាស់នៅថ្ងៃបរលោកយើងមានខ្សែច្រវ៉ាក់ដ៏ធ្ងន់និងភ្លើងនរកដើហ៊ីម
សម្រាប់ពួកគេ។
13 និងចំណីអាហារដ៏អាក្រក់ដែលធ្វើឱ្យគេស្លាក់ហើយនិងទារុណកម្មដ៏សែនឈឺ
ចាប់ថែមទៀតផង។
14 ទារុណកម្មនោះនឹងកើតឡើងលើអ្នកដែលបដិសេធក្នុងថ្ងៃរញ្ជួយផ្ទៃផែនដីនិងភ្នំ។ហើយ
ភ្នំនឹងក្លាយទៅ ជាពំនូកខ្សាច់ដែលបើងខ្ចាត់ខ្ចាយដោយសារការរញ្ជួយដ៏ខ្លាំងក្លា។
15 ពិតប្រាកដណាស់យើងបានបញ្ជូនអ្នកនាំសារម្នាក់ទៅកាន់ពួកអ្នកដែលធ្វើជា
សាក្សីលើទង្វើរបស់ពួកអ្នកនៅថ្ងៃបរលោក។ដូចជាយើងបានបញ្ជូនអ្នកនាំសារមូសា
ទៅកាន់ហ្វៀរអោននោះដែរ។
16 ហើយហ្វៀរអោនបានប្រឆាំងនឹងអ្នកនាំសារនោះ។យើងក៏បានដាក់ទារុណកម្ម
គេដ៏ធ្ងន់ធ្ងរនៅលើលោកិយដោយការលិចលង់ស្លាប់ហើយនៅថ្ងៃបរលោកគេនឹង
ទទួលទារុណកម្មភ្លើងនរក។ដូច្នេះចូរពួកអ្នកកុំប្រឆាំនឹងអ្នកនាំសាររបស់ពួកវានាំឱ្យ
ពួកអ្នកទទួលរងដូចគេដែរ។
17 តើពួកអ្នកការពារខ្លួនរបស់ពួកអ្នកយ៉ាងដូចម្ដេច ?បើសិនជាពួកអ្នកនៅតែ
ប្រឆាំងចំពោះអល់ឡោះនិងរ៉សូលុលឡោះអ៊ីចឹងនោះ។នៅក្នុងថ្ងៃដែលរយៈពេលយូ
បំផុត។ធ្វើឱ្យក្មេងតូចក្លាយជាសក់ស្កូវដោយរន្ធត់ខ្លាំងពេក។
18 មេឃប្រេះបែកនិងបាក់ខ្ទេចខ្ទីដោយសារតែការភ័យរន្ធត់ខ្លាំងពេកនៅថ្ងៃនោះ។
ការសន្យារបស់ទ្រង់នឹងកើតឡើងដាច់ខាតមិនអាចខកខានឡើយ។

إِنَّ هَٰذِهِۦ تَذۡكِرَةٞۖ فَمَن شَآءَ ٱتَّخَذَ إِلَىٰ رَبِّهِۦ سَبِيلًا ١٩ إِنَّ رَبَّكَ يَعۡلَمُ أَنَّكَ تَقُومُ أَدۡنَىٰ مِن
ثُلُثَيِ ٱلَّيۡلِ وَنِصۡفَهُۥ وَثُلُثَهُۥ وَطَآئِفَةٞ مِّنَ ٱلَّذِينَ مَعَكَۚ وَٱللَّهُ يُقَدِّرُ ٱلَّيۡلَ وَٱلنَّهَارَۚ عَلِمَ أَن لَّن
تُحۡصُوهُ فَتَابَ عَلَيۡكُمۡۖ فَٱقۡرَءُواْ مَا تَيَسَّرَ مِنَ ٱلۡقُرۡءَانِۚ عَلِمَ أَن سَيَكُونُ مِنكُم مَّرۡضَىٰ وَءَاخَرُونَ




يَضْرِبُونَ فِي ٱلْأَرْضِ يَبْتَغُونَ مِن فَضْلِ ٱللَّهِ وَءَاخَرُونَ يُقَٰتِلُونَ فِي سَبِيلِ ٱللَّهِ فَٱقْرَءُواْ مَا تَيَسَّرَ مِنْهُ وَأَقِيمُواْ ٱلصَّلَوٰةَ وَءَاتُواْ ٱلزَّكَوٰةَ وَأَقْرِضُواْ ٱللَّهَ قَرْضًا حَسَنًا وَمَا تُقَدِّمُواْ لِأَنفُسِكُم مِّنْ خَيْرٍ تَجِدُوهُ عِندَ ٱللَّهِ هُوَ خَيْرًا وَأَعْظَمَ أَجْرًا وَٱسْتَغْفِرُواْ ٱللَّهَ إِنَّ ٱللَّهَ غَفُورٌ رَّحِيمٌ

(19) ពិតប្រាកដណាស់រឿងទាំងនេះគឺជាការរំលឹកមួយដែលក្នុងនេះមានការបក ស្រាយពីថ្ងៃបរលោកនិងភាពភ័យរន្ធត់ខ្លាំងដែលជាមេរៀនមួយសម្រាប់អ្នកមានជំនឿ។ដូច្នេះអ្នកណាហើយចង់រួចផុតពីទារុណកម្មគេពិតជាជ្រើសរើសយកមាគ៌ាទៅកាន់ម្ចាស់របស់គេជាមិនខាន។

(20) ពិតប្រាកដណាស់ម្ចាស់របស់អ្នក(មូហាំម៉ាត់)ដឹងថា៖អ្នកពិតជាក្រោកថ្វាយបង្គំតិចជាងពីរភាគបីនៃពេលយប់។ជួនកាលពាក់កណ្ដាលយប់និងជួនកាលមួយភាគបីនៃពេលយប់។ហើយមួយក្រុមនៃអ្នកមានជំនឿដែលនៅជាមួយនឹងអ្នកក៏ធ្វើដូច្នោះដែរ។ហើយអល់ឡោះគឺជាអ្នកកំណត់ពេលយប់និងពេលថ្ងៃ។ទ្រង់ដឹងច្បាស់ពីបរិមាណពេលយប់និងពេលថ្ងៃ។ទ្រង់ដឹងថាពួកអ្នកអសមត្ថភាពដឹងពីរយៈពេលយប់និងថ្ងៃ។ទ្រង់បានដឹងថាពួកអ្នកមិនអាចឈរសឡាតពេញមួយយប់បានឡើយ។ដូច្នេះទ្រង់បានបន្ធូរបន្ថយដល់ពួកអ្នក។ហើយចូរពួកអ្នកសឡាតដោយសូត្រអ្វីដែលងាយស្រួលអំពីគម្ពីរគួរអានចុះ។ទ្រង់ក៏បានដឹងដែរថានៅក្នុងចំណោមពួកអ្នក(អ្នកមានជំនឿ)មានអ្នកដែលអសមត្ថភាពក្រោកឈរសឡាតពេលយប់ដោយឈឺ។ហើយអ្នកខ្លះត្រូវធ្វើដំណើរលើផែនដីដើម្បីស្វែងរកលាភសក្ការៈរបស់អល់ឡោះ។ហើយអ្នកខ្លះទៀតត ស៊ូប្រយុទ្ធក្នុងមាគ៌ារបស់អល់ឡោះ។ពួកគេគ្មានសមត្ថភាពក្រោកឈរសឡាតពេលយប់នោះទេ។ដូច្នេះចូរពួកអ្នកសឡាតដោយសូត្រអ្វីដែលងាយស្រួលអំពីគម្ពីរគួរអានចុះ។ហើយចូរពួកអ្នកប្រតិបត្តិសឡាតកាតព្វកិច្ចឱ្យបានល្អពេញលេញនិងបរិច្ចាគហ្សាកាត់អំពីទ្រព្យសម្បត្តិរបស់ពួកគេនិងបរិច្ចាគទានតាមមាគ៌ាអល់ឡោះ។ហើយអ្វីដែលពួកអ្នកបានសាងសម្រាប់ខ្លួនឯងអំពីប្រការល្អនោះពួកអ្នកនឹងទទួលបាននូវភាពល្អប្រសើរនិងផលបុណ្យដ៏ធំធេងពីអល់ឡោះវិញ។ហើយចូរពួកអ្នកសុំអភ័យទោសពីអល់ឡោះ។ពិតប្រាកដណាស់អល់ឡោះមហាអភ័យទោសមហាអាណិតស្រឡាញ់។

## អាល់មុដដាសសៀរ

**គោលបំណងនៃស៊ូរ៉ោះ**

ការបង្គាប់ប្រើឱ្យដាស់តឿនព្រមានដល់អ្នកដែលបដិសេធក្នុងពេលអំពាវនាវ។

**តាហ្វសៀរ**

يَٰٓأَيُّهَا ٱلْمُدَّثِّرُ ﴿١﴾ قُمْ فَأَنذِرْ ﴿٢﴾ وَرَبَّكَ فَكَبِّرْ ﴿٣﴾ وَثِيَابَكَ فَطَهِّرْ ﴿٤﴾ وَٱلرُّجْزَ فَٱهْجُرْ ﴿٥﴾ وَلَا تَمْنُن تَسْتَكْثِرُ ﴿٦﴾ وَلِرَبِّكَ فَٱصْبِرْ ﴿٧﴾ فَإِذَا نُقِرَ فِي ٱلنَّاقُورِ ﴿٨﴾ فَذَٰلِكَ يَوْمَئِذٍ يَوْمٌ عَسِيرٌ ﴿٩﴾ عَلَى ٱلْكَٰفِرِينَ غَيْرُ يَسِيرٍ ﴿١٠﴾

(1) ឱអ្នកដណ្ដប់ភួយ(គឺណាពីមូហាំម៉ាត់)។

(2) ចូរក្រោកឡើងហើយទូន្មានដាស់តឿនព្រមានមនុស្សឱ្យខ្លាចទារុណកម្មរបស់អល់ឡោះ។

(3) ហើយចូរអ្នកលើកតម្កើងម្ចាស់របស់អ្នកចុះ។

(4) ហើយចូរអ្នកសម្អាតខ្លួនរបស់អ្នកនិងសំលៀកបំពាក់របស់អ្នកពីភាពកខ្វក់។

(5) ហើយចូរអ្នកចៀសវាងឱ្យឆ្ងាយពីការគោរពសក្ការៈរូបបដិមា។





(6) ចូរកុំរំលើកគុណដល់ម្ចាស់របស់អ្នកដោយការធ្វើទង្វើល្អជាច្រើនរបស់អ្នក។
(7) ចូរអត់ធ្មត់នឹងផលលំបាកដែលអ្នកបានជួបដើម្បីអល់ឡោះ។
(8) នៅពេលដែលគេផ្លុំត្រែលើកទីពីរ។
(9) គឺថ្ងៃនោះហើយជាថ្ងៃដែលលំបាកបំផុត។
(10) ចំពោះពួកប្រឆាំងនឹងអល់ឡោះនិងរ៉សូលរបស់ទ្រង់គឺមិនងាយស្រួលឡើយ។

ذَرۡنِي وَمَنۡ خَلَقۡتُ وَحِيدٗا ﴿١١﴾ وَجَعَلۡتُ لَهُۥ مَالٗا مَّمۡدُودٗا ﴿١٢﴾ وَبَنِينَ شُهُودٗا ﴿١٣﴾ وَمَهَّدتُّ لَهُۥ
تَمۡهِيدٗا ﴿١٤﴾ ثُمَّ يَطۡمَعُ أَنۡ أَزِيدَ ﴿١٥﴾ كَلَّآۖ إِنَّهُۥ كَانَ لِأٓيَٰتِنَا عَنِيدٗا ﴿١٦﴾ سَأُرۡهِقُهُۥ صَعُودًا ﴿١٧﴾ إِنَّهُۥ
فَكَّرَ وَقَدَّرَ ﴿١٨﴾ فَقُتِلَ كَيۡفَ قَدَّرَ ﴿١٩﴾ ثُمَّ قُتِلَ كَيۡفَ قَدَّرَ ﴿٢٠﴾ ثُمَّ نَظَرَ ﴿٢١﴾ ثُمَّ عَبَسَ وَبَسَرَ ﴿٢٢﴾ ثُمَّ
أَدۡبَرَ وَٱسۡتَكۡبَرَ ﴿٢٣﴾ فَقَالَ إِنۡ هَٰذَآ إِلَّا سِحۡرٞ يُؤۡثَرُ ﴿٢٤﴾ إِنۡ هَٰذَآ إِلَّا قَوۡلُ ٱلۡبَشَرِ ﴿٢٥﴾ سَأُصۡلِيهِ
سَقَرَ ﴿٢٦﴾ وَمَآ أَدۡرَىٰكَ مَا سَقَرُ ﴿٢٧﴾ لَا تُبۡقِي وَلَا تَذَرُ ﴿٢٨﴾ لَوَّاحَةٞ لِّلۡبَشَرِ ﴿٢٩﴾ عَلَيۡهَا تِسۡعَةَ عَشَرَ ﴿٣٠﴾

(11) ទុកឱ្យយើងចាត់ការចំពោះមនុស្សដែលយើងបានបង្កើតគេនៅតែឯងក្នុងផ្ទៃម្ដាយរបស់គេ។គេគ្មាននាំទ្រព្យនិងកូនមកជាមួយនោះទេ(គាត់គឺអាលវ៉ាលីទ ពីន មូហ្គីរ៉ោះ)។
(12) យើងបានធ្វើឱ្យគេក្លាយជាអ្នកមានទ្រព្យសម្បត្តិស្ដុកស្ដម្ភ។
(13) យើងបានប្រទានឱ្យគេមានកូនច្រើនរស់នៅជុំគ្នាពួកគេមិនចាំបាច់រស់នៅបែកខ្ញែកគ្នាធ្វើចំណាកស្រុកឡើយដោយសារពួកគេជាអ្នកមានទ្រព្យសម្បត្តិស្ដុកស្ដម្ភ។
(14) យើងបានប្រទានឱ្យជីវិតរស់នៅរបស់គេស្រណុកសុខស្រួលមានលាភសក្ការៈនិងមានកូនចៅជាច្រើន។
(15) បន្ទាប់មកគេមានភាពលោភលន់ចង់ឱ្យយើងបន្ថែមឱ្យគេទៀត។
(16) មិនដូច្នោះទេ!ពិតប្រាកដណាស់គេគឺជាអ្នកដែលប្រឆាំងរឹងរូសចំពោះបណ្ដាអាយ៉ាត់របស់យើងដែលបានបញ្ចុះមកលើអ្នកនាំសារ។
(17) យើងនឹងដាក់ទារុណកម្មលើគេឱ្យកាន់តែខ្លាំងនិងកាន់តែវេទនារហូតដល់គេមិនអាចទ្រាំទ្របាន។
(18) យពួកអ្នកប្រឆាំងដែលត្រូវបានគេផ្ដលលាភសក្ការៈដល់ពួកគេនោះគេបានរិះគិតពាក្យសំដីដើម្បីបដិសេធគម្ពីគួរអាននិងបានរៀបគំរោងធ្វើអាក្រក់ក្នុងខ្លួនរបស់គេ។
(19) គេត្រូវបានដាក់បណ្ដាសានិងធ្វើទារុណកម្ម។តើគេរៀបគំរោងធ្វើអាក្រក់បានយ៉ាងដូចម្ដេច?
(20) បន្ទាប់មកគេត្រូវបានដាក់បណ្ដាសានិងធ្វើទារុណកម្ម។តើគេរៀបគំរោងធ្វើអាក្រក់បានយ៉ាងដូចម្ដេច?
(21) បន្ទាប់មកគេគិតថាធ្វើយ៉ាងម៉េចដើម្បីចាប់កំហុសអ្វីដែលមាននៅក្នុងអាល់គួរអាន។
(22) បន្ទាប់មកគេធ្វើមុខក្រញូវនិងខឹងមួម៉ៅប្រែទឹកមុខនៅពេលគេគ្មានអ្វីចាប់កំហុសនៅក្នុងអាល់គួរអាន។
(23) ក្រោយមកគេបានបែរចេញពីការមានជំនឿនិងបានក្រអឺតក្រទមមិនព្រមតាមណាពីថែមទៀត។
(24) គេនិយាយថា៖អ្វីដែលមូហាំម៉ាត់នាំមកមិនមែនជាបន្ទូលរបស់អល់ឡោះទេវាជាមន្តអាគមដែលអ្នកដទៃមកតែប៉ុណ្ណោះ។
(25) វាជាពាក្យសម្ដីរបស់មនុស្សពុំមែនជាព្រះបន្ទូលរបស់អល់ឡោះនោះទេ។
(26) យើងនឹងបញ្ចូលពួកអ្នកប្រឆាំងទៅក្នុងភ្លើងនរកដែលមានឈ្មោះថាសាក៉រឱ្យពួកគេភ្លក់កម្ដៅរបស់វា។





27 តើអ្វីដែលធ្វើឱ្យអ្នក(ម៉ូហាំម៉ាត់)ដឹងថានរកសាក័រជាអ្វីនោះ?
28 វាមិនបន្សល់ទុកអ្វីម្យ៉ាងលើអ្នកទទួលទារុណកម្មឡើយហើយក៏មិនចោលគេដែរ។
បន្ទាប់មកគេនឹងត្រូវឡប់មកដូចដើមហើយក៏ទទួលទារុណកម្មនោះទៀតបែបនេះរហូត។
29 ភ្លើងនរកធ្វើឱ្យស្បែករបស់ពួកគេប្រែទៅជាខ្មៅ។
30 នៅលើឋាននរកមានម៉ាឡាអ៊ីកាត់ចំនួន១៩នាក់កំពុងយាមការពារ។

وَمَا جَعَلۡنَآ أَصۡحَٰبَ ٱلنَّارِ إِلَّا مَلَٰٓئِكَةٗۖ وَمَا جَعَلۡنَا عِدَّتَهُمۡ إِلَّا فِتۡنَةٗ لِّلَّذِينَ كَفَرُواْ لِيَسۡتَيۡقِنَ
ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ وَيَزۡدَادَ ٱلَّذِينَ ءَامَنُوٓاْ إِيمَٰنٗا وَلَا يَرۡتَابَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ وَٱلۡمُؤۡمِنُونَ
وَلِيَقُولَ ٱلَّذِينَ فِي قُلُوبِهِم مَّرَضٞ وَٱلۡكَٰفِرُونَ مَاذَآ أَرَادَ ٱللَّهُ بِهَٰذَا مَثَلٗاۚ كَذَٰلِكَ يُضِلُّ ٱللَّهُ
مَن يَشَآءُ وَيَهۡدِي مَن يَشَآءُۚ وَمَا يَعۡلَمُ جُنُودَ رَبِّكَ إِلَّا هُوَۚ وَمَا هِيَ إِلَّا ذِكۡرَىٰ لِلۡبَشَرِ ٣١
كَلَّا وَٱلۡقَمَرِ ٣٢ وَٱلَّيۡلِ إِذۡ أَدۡبَرَ ٣٣ وَٱلصُّبۡحِ إِذَآ أَسۡفَرَ ٣٤ إِنَّهَا لَإِحۡدَى ٱلۡكُبَرِ ٣٥
نَذِيرٗا لِّلۡبَشَرِ ٣٦ لِمَن شَآءَ مِنكُمۡ أَن يَتَقَدَّمَ أَوۡ يَتَأَخَّرَ ٣٧

31 ហើយយើងមិនបានបង្កើតអ្នកការពារនរកក្រៅពីម៉ាឡាអ៊ីកាត់ឡើយ។មនុស្សគ្មាន
សមត្ថភាពអាចធ្វើបានទេ។ពិតណាស់អាពូជើហ៊ុលបានបដិសេធខណៈដែលគេ
អះអាងថាគេនិងក្រុមរបស់គេអាចទប់ទល់នឹងទារុណកម្មបានបន្ទាប់មកពួកគេនឹង
ចេញពីឋាននរក។ហើយយើងមិនបានបង្កើតចំនួនរបស់ពួកគេឡើយលើកលែងតែជា
ការសាកល្បងចំពោះពួកដែលគ្មានជំនឿនឹងអល់ឡោះប៉ុណ្ណោះ។រហូតដល់ពួកគេ
ហ៊ាននិយាយផ្ដេសផ្ដាសហើយទារុណកម្មរបស់ពួកគេកាន់តែកើនឡើងទ្វេដង។និងដើម្បីឱ្យ
បណ្ដាពួកយ៉ាហ៊ូទីដែលបានទទួលគម្ពីរតាវរ៉តនិងពួកណាសរ៉នីដែលបានទទួលគម្ពីរអ៊ិន
ជីលជឿជាក់យ៉ាងច្បាស់លើការបញ្ចុះគម្ពីរគួរអានដែលបញ្ចុះមកដើម្បីបញ្ជាក់លើគម្ពីររប
ស់ពួកគេ។និងដើម្បីឱ្យបណ្ដាអ្នកដែលមានជំនឿមានការជឿជាក់ថែមទៀតខណៈ
ដែលមានភាពស្របគ្នាជាមួយពួកដែលទទួលគម្ពីរ។និងដើម្បីកុំឱ្យអ្នកដែលបានទទួល
គម្ពីរនិងបណ្ដាអ្នកដែលមានជំនឿមានការសង្ស័យ។និងដើម្បីឱ្យបណ្ដាអ្នកដែលមាន
ជំងឺនៅក្នុងចិត្តរបស់ពួកគេនិងពួកដែលប្រឆាំងនិយាយថា៖តើអល់ឡោះមានបំណងអ្វី
ចំពោះចំនួនទាំងនេះ។ដូច្នេះដែរអល់ឡោះធ្វើឱ្យវង្វេងចំពោះអ្នកណាដែលទ្រង់មាន
ចេតនាហើយក៏ចង្អុលបង្ហាញចំពោះអ្នកណាដែលទ្រង់មានចេតនាដែរ។ហើយគ្មាន
នរណាម្នាក់ដឹងពីចំនួនកងទ័ពនៃម្ចាស់របស់អ្នកក្រៅពីទ្រង់ឡើយហើយវា(នរកសាក័
រ)ក៏គ្មានអ្វីក្រៅពីជាការរំលឹកដល់មនុស្សលោកពីភាពខ្លាំងពូកែរបស់អល់ឡោះដែរ។
32 វាមិនដូចអ្វីដែលពួកគ្មានជំនឿខ្លះបានអះអាងថាគេនិងក្រុមរបស់គេអាចយកឈ្នះ
អ្នកការពារនរកហើយពួកគេនឹងចេញពីវាវិញឡើយ។អល់ឡោះស្បថនឹងព្រះច័ន្ទ។
33 ទ្រង់បានស្បថនឹងពេលយប់ខណៈដែលបានរំលងផុតទៅ។
34 ទ្រង់ស្បនឹងពេលព្រឹកនៅពេលដែលវាបញ្ចេញពន្លឺ។
35 ឋាននរកសាក័រជាគ្រោះកម្មឬវិបត្តិដ៏ធំ។
36 ដើម្បីជាការព្រមាននិងបំភ័យដល់មនុស្សលោក។
37 ក្នុងចំណោមពួកអ្នក(មនុស្សលោក)នរណាគេចង់ដើរទៅមុខដោយមានជំនឿ
ចំពោះអល់ឡោះនឹងប្រតិបត្តទង្វើកុសលឬនរណាចង់ដើរថយក្រោយដោយការ
ប្រឆាំងនិងធ្វើអាក្រក់។

كُلُّ نَفۡسِۭ بِمَا كَسَبَتۡ رَهِينَةٌ ٣٨ إِلَّآ أَصۡحَٰبَ ٱلۡيَمِينِ ٣٩ فِي جَنَّٰتٖ يَتَسَآءَلُونَ ٤٠ عَنِ



ٱلۡمُجۡرِمِينَ ﴿٤١﴾ مَا سَلَكَكُمۡ فِي سَقَرَ ﴿٤٢﴾ قَالُواْ لَمۡ نَكُ مِنَ ٱلۡمُصَلِّينَ ﴿٤٣﴾ وَلَمۡ نَكُ نُطۡعِمُ
ٱلۡمِسۡكِينَ ﴿٤٤﴾ وَكُنَّا نَخُوضُ مَعَ ٱلۡخَآئِضِينَ ﴿٤٥﴾ وَكُنَّا نُكَذِّبُ بِيَوۡمِ ٱلدِّينِ ﴿٤٦﴾ حَتَّىٰٓ أَتَىٰنَا
ٱلۡيَقِينُ ﴿٤٧﴾ فَمَا تَنفَعُهُمۡ شَفَٰعَةُ ٱلشَّٰفِعِينَ ﴿٤٨﴾ فَمَا لَهُمۡ عَنِ ٱلتَّذۡكِرَةِ مُعۡرِضِينَ ﴿٤٩﴾ كَأَنَّهُمۡ
حُمُرٞ مُّسۡتَنفِرَةٞ ﴿٥٠﴾ فَرَّتۡ مِن قَسۡوَرَةِۭ ﴿٥١﴾ بَلۡ يُرِيدُ كُلُّ ٱمۡرِيٕٖ مِّنۡهُمۡ أَن يُؤۡتَىٰ صُحُفٗا
مُّنَشَّرَةٗ ﴿٥٢﴾ كَلَّاۖ بَل لَّا يَخَافُونَ ٱلۡأٓخِرَةَ ﴿٥٣﴾ كَلَّآ إِنَّهُۥ تَذۡكِرَةٞ ﴿٥٤﴾ فَمَن شَآءَ ذَكَرَهُۥ ﴿٥٥﴾
وَمَا يَذۡكُرُونَ إِلَّآ أَن يَشَآءَ ٱللَّهُۚ هُوَ أَهۡلُ ٱلتَّقۡوَىٰ وَأَهۡلُ ٱلۡمَغۡفِرَةِ

(38) រាល់ជីវិតនីមួយៗគេយកទោសតាមទង្វើរបស់គេ។ជួនកាលទង្វើរបស់គេអាច
បំផ្លាញគេឬជួនកាលទង្វើរបស់គេអាចជួយសង្គ្រោះគេ។
(39) លើកលែងតែពួកអ្នកមានជំនឿពួកគេមិនជាប់បំណុលនឹងអំពើបាបរបស់ពួកគេ
ទេ។តែពួកគេលោះខ្លួនដោយការធ្វើអំពើកុសលរបស់ពួកគេ។
(40) ក្នុងថ្ងៃបរលោកពួកគេសួរគ្នាទៅវិញទៅមកនៅក្នុងឋានសួគ៌។
(41) អំពីពួកគ្មានជំនឿដែលបានបំផ្លាញខ្លួនរបស់ពួកគេដោយប្រព្រឹត្តបាបកម្ម។
(42) ពួកអ្នកមានជំនឿសួរពួកគេថាហេតុអ្វីបានជាគេបញ្ចូលពួកអ្នកទៅក្នុងនរកចា
ហាន់ណាំ?
(43) ពួកគេបានឆ្លើយថា៖ពួកយើងកាលពីមុនមិនបានស្ថិតក្នុងចំណោមអ្នកដែល
ប្រតិបត្តិសឡាតឡើយក្នុងពេលរស់នៅលើលោកិយ៍។
(44) ហើយយើងមិនធ្លាប់បានផ្តល់ចំណីអាហារដល់អ្នកក្រីក្រឡើយនូវអ្វីដែលអល់
ឡោះបានផ្តល់ឱ្យពួកយើង។
(45) ពួកយើងបានស្ថិតនៅជាមួយនឹងពួកអ្នកដើរផ្លូវខុស។រាល់ពេលពួកគេវង្វេងយើង
ក៏វង្វេងតាមពួកគេដែរ។
(46) ពួកយើងបដិសេធមិនជឿនឹងថ្ងៃជំនុំជំរះ។
(47) ហើយពួកយើងនៅតែបដិសេធបែបនេះរហូតទាល់តែសេចក្តីស្លាប់បានមកដល់
ពួកយើង។
(48) ហើយការធ្វើអន្តរាគមន៍ពីបណ្តាម៉ាឡើអ៊ីកាត់បណ្តាណាពីនិងបណ្តាបុគ្គលគុស
លគឺគ្មានផលប្រយោជន៍អ្វីដល់ពួកគេឡើយ។
(49) តើមានរឿងហេតុអ្វីកើតឡើងទើបធ្វើឱ្យពួកគេងាកចេញពីគម្ពីរអាល់គួរអាន?
(50) ការងាកចេញរបស់ពួកគេប្រៀបដូចជាសត្វលាដែលផ្អើល។
(51) ពួកគេហាក់បីដូចជាសត្វលាដែលរត់គេចពីការតាមប្រមាញ់របស់សត្វតោ។
(52) ផ្ទុយទៅវិញពួកគេចង់ឱ្យអល់ឡោះបញ្ចុះគីតាបមកឱ្យម្នាក់មួយដើម្បីបញ្ជាក់ថាមូ
ហាំម៉ាត់ពិតជារ៉សូលរបស់អល់ឡោះ។ហើយមូលហេតុដែលនាំឱ្យកើតបែបនេះគឺមិន
មែនមកពីភស្តុតាងមានតិចឬខ្សោយនោះទេប៉ុន្តែគឺដោយសារភាពចចេសរឹងរូសនិង
ភាពក្រអឺតក្រទម។
(53) មិនដូច្នោះទេផ្ទុយទៅវិញពួកគេមិនមានជំនឿនឹងថ្ងៃបរលោកឡើយដោយសារ
ការវង្វេងក្នុងភាពវង្វេងរបស់ពួកគេហើយពួកគេក៏ស្ថិតលើភាពគ្មានជំនឿរបស់ពួក
គេនោះ។
(54) ពិតប្រាកដណាស់គម្ពីរគួរអានគឺជាដាស់តឿននិងការរំលឹក។
(55) អ្នកណាហើយមានបំណងសូត្រគម្ពីគួរអានគេពិតជានឹងយកវាធ្វើជាមេរៀន។





(56) ហើយពួកគេមិនទទួលវាយកជាមេរៀនឡើយលើកលែងតែអល់ឡោះមានចេតនាប៉ុណ្ណោះ។ទ្រង់គឺជាម្ចាស់ដែលត្រូវគេកោតខ្លាចដោយការគោរពតាមបទបញ្ជារបស់ទ្រង់និងជៀសវាងពីអ្វីដែលទ្រង់ហាមឃាត់និងជាម្ចាស់ដែលអភ័យទោសដល់ខ្ញុំរបស់ទ្រង់នៅពេលដែលពួកគេទទួលសារភាពកំហុស។

## អាល់គីយ៉ាម៉ះ

**គោលបំណងនៃស៊ូរ៉ោះ**

បង្ហាញពីឧត្តមភាពរបស់អល់ឡោះលើការប្រមូលផ្ដុំមនុស្សនិងធ្វើឱ្យរស់ឡើងវិញ។

**តាហ្វសៀរ**

لَآ أُقۡسِمُ بِيَوۡمِ ٱلۡقِيَٰمَةِ ﴿١﴾ وَلَآ أُقۡسِمُ بِٱلنَّفۡسِ ٱللَّوَّامَةِ ﴿٢﴾ أَيَحۡسَبُ ٱلۡإِنسَٰنُ أَلَّن نَّجۡمَعَ
عِظَامَهُۥ ﴿٣﴾ بَلَىٰ قَٰدِرِينَ عَلَىٰٓ أَن نُّسَوِّيَ بَنَانَهُۥ ﴿٤﴾ بَلۡ يُرِيدُ ٱلۡإِنسَٰنُ لِيَفۡجُرَ أَمَامَهُۥ ﴿٥﴾ يَسۡـَٔلُ
أَيَّانَ يَوۡمُ ٱلۡقِيَٰمَةِ ﴿٦﴾ فَإِذَا بَرِقَ ٱلۡبَصَرُ ﴿٧﴾ وَخَسَفَ ٱلۡقَمَرُ ﴿٨﴾ وَجُمِعَ ٱلشَّمۡسُ وَٱلۡقَمَرُ ﴿٩﴾ يَقُولُ
ٱلۡإِنسَٰنُ يَوۡمَئِذٍ أَيۡنَ ٱلۡمَفَرُّ ﴿١٠﴾ كَلَّا لَا وَزَرَ ﴿١١﴾ إِلَىٰ رَبِّكَ يَوۡمَئِذٍ ٱلۡمُسۡتَقَرُّ ﴿١٢﴾ يُنَبَّؤُاْ ٱلۡإِنسَٰنُ
يَوۡمَئِذِۭ بِمَا قَدَّمَ وَأَخَّرَ ﴿١٣﴾ بَلِ ٱلۡإِنسَٰنُ عَلَىٰ نَفۡسِهِۦ بَصِيرَةٞ ﴿١٤﴾ وَلَوۡ أَلۡقَىٰ مَعَاذِيرَهُۥ ﴿١٥﴾

(1) អល់ឡោះបានស្បថនឹងថ្ងៃបរលោក( ថ្ងៃគីយ៉ាម៉ាត់ )ជាថ្ងៃដែលមនុស្សលោកត្រឡប់ទៅរកអល់ឡោះ។

(2) ទ្រង់ស្បថនឹងវិញ្ញាណដ៏បរិសុទ្ធដែលតែងបន្ទោសចំពោះកំហុសរបស់ខ្លួនដែលមិនបានធ្វើទង្វើកុសលច្រើននិងស្ដាយក្រោយលើការប្រព្រឹត្តិអំពើអាក្រក់។ទ្រង់ស្បថនឹងពីរប្រការនេះថាទ្រង់នឹងធ្វើឱ្យមនុស្សទាំងអស់រស់ឡើងវិញដើម្បីជំនុំជំរះពួកគេនិងតស៊ូងដល់ពួកគេ។

(3) តើមនុស្សគិតស្មានថាយើងមិនប្រមូលឆ្អឹងរបស់ពួកគេបន្ទាប់ពីពួកគេបានស្លាប់ដើម្បីធ្វើឱ្យគេរស់ឡើងវិញមែនទេ ?

(4) ពិតណាស់យើងមានអានុភាពគ្រប់គ្រាន់ក្នុងការប្រមូលវាឡើងវិញ។យើងអាចប្រមូលចុងម្រាមដៃរបស់គេហើយបង្កើតវាឱ្យដូចដើមវិញ។

(5) ផ្ទុយទៅវិញដោយភាពគ្មានជំនឿនឹងការធ្វើឱ្យរស់ឡើងវិញមនុស្សចង់ប្រព្រឹត្តអំពើអាក្រក់បន្តទៅអនាគតទៀត។

(6) គេសួរក្នុងបំណងសើចចំអកមើលងាយថាតើថ្ងៃបរលោកនឹងកើតឡើងនៅពេលណា ?

(7) នៅពេលភ្នែកភ័យស្លន់ស្លោស្រឡាំងកាំងខណៈដែលឃើញនូវអ្វីដែលពួកគេបានបដិសេធកើតឡើង។

(8) ព្រះចន្ទបានបាត់បង់ពន្លឺ។

(9) ហើយព្រះអាទិត្យនិងព្រះចន្ទត្រូវបានគេប្រមូលផ្ដុំ។

(10) នៅថ្ងៃនោះមនុស្សប្រព្រឹត្តបទល្មើសនិយាយថាតើមានទីណាសម្រាប់រត់គេច ?

(11) ទេ !គ្មានកន្លែងរត់គេចឡើយក្នុងថ្ងៃនោះ។គ្មានទីជម្រករត់គេចសម្រាប់អ្នកប្រព្រឹត្តបទល្មើសឡើយ។

(12) កន្លែងវិលត្រឡប់នៅថ្ងៃនោះមានតែឆ្ពោះទៅកាន់ម្ចាស់របស់អ្នកប៉ុណ្ណោះដើម្បីជំនុំជំរះនិងតស៊ូង។

(13) នៅថ្ងៃនោះមនុស្សលោកត្រូវគេប្រាប់នូវអ្វីដែលគេបានប្រព្រឹត្តកន្លងមកនិងអ្វីដែលគេមិនបានប្រព្រឹត្ត។



14 ផ្ទុយទៅវិញមនុស្សលោកគឺជាអ្នកធ្វើសាក្សីលើខ្លួនឯងដោយគ្រប់អវៈយវៈទាំង
អស់ធ្វើសាក្សីលើខ្លួនឯង។
15 ទោះបីជាគេដោះសារយ៉ាងណាក៏ដោយក៏គ្មានប្រយោជន៍អ្វីសម្រាប់ខ្លួនគេនោះទេ។

لَا تُحَرِّكۡ بِهِۦ لِسَانَكَ لِتَعۡجَلَ بِهِۦٓ ﴿١٦﴾ إِنَّ عَلَيۡنَا جَمۡعَهُۥ وَقُرۡءَانَهُۥ ﴿١٧﴾ فَإِذَا قَرَأۡنَٰهُ فَٱتَّبِعۡ قُرۡءَانَهُۥ
﴿١٨﴾ ثُمَّ إِنَّ عَلَيۡنَا بَيَانَهُۥ ﴿١٩﴾ كَلَّا بَلۡ تُحِبُّونَ ٱلۡعَاجِلَةَ ﴿٢٠﴾ وَتَذَرُونَ ٱلۡأٓخِرَةَ ﴿٢١﴾ وُجُوهٞ يَوۡمَئِذٖ
نَّاضِرَةٌ ﴿٢٢﴾ إِلَىٰ رَبِّهَا نَاظِرَةٞ ﴿٢٣﴾ وَوُجُوهٞ يَوۡمَئِذِۭ بَاسِرَةٞ ﴿٢٤﴾ تَظُنُّ أَن يُفۡعَلَ بِهَا فَاقِرَةٞ ﴿٢٥﴾

16 ចូរអ្នក(មូហាំម៉ាត់)កុំកម្រើកអណ្តាតរបស់អ្នកលឿនពេកនៅពេលសូត្រវា
ដោយសារប្រញាប់ចង់ទន្ទេញវា។
17 យើងជាអ្នកទទួលខុសត្រូវថែរក្សាវានៅក្នុងទ្រូងរបស់អ្នក។ហើយឱ្យអ្នកសូត្រវា
បានត្រឹមត្រូវ។
18 បើសិនជាយើងបង្រៀនអ្នកសូត្រចប់តាមរយៈជីព្រីលរួច។ចូរនៅឱ្យស្ងាមត្រង់
ត្រាប់ស្តាប់ការសូត្ររបស់គេ។
19 បន្ទាប់មកយើងជាអ្នកបកស្រាយបញ្ជាក់ប្រាប់ដល់អ្នក។
20 ទេ!វាមិនដូចអ្វីដែលពួកអ្នកអះអាងថាមិនអាចទៅរួចទេដែលមានការរស់ឡើង
វិញពីព្រោះពួកអ្នកបានដឹងថាលទ្ធភាពដែលអាចបង្កើតពួកអ្នកពីគ្មានមិនអាចថា
គ្មានលទ្ធភាពក្នុងការធ្វើឱ្យរស់ឡើងវិញឡើយផ្ទុយទៅវិញមូលហេតុពិតនោះគឺពួក
អ្នកស្រឡាញ់ចូលចិត្តការរស់នៅក្នុងលោកិយនេះ។
21 ហើយពួកអ្នកបោះបង់ថ្ងៃបរលោកជាមាគ៌ាដែលអល់ឡោះប្រើឱ្យពួកអ្នកគោរព
ប្រតិបត្តិនិងបោះបង់អ្វីដែលទ្រង់ហាមឃាត់។
22 នៅថ្ងៃនោះទឹកមុខអ្នកមានជំនឿទាំងឡាយរីករាយស្រស់ស្រាយនិងស្អាតផូរផង់។
23 សម្លឹងមើលទៅកាន់ព្រះជាម្ចាស់របស់ខ្លួន។
24 ហើយនៅថ្ងៃនោះទឹកមុខអ្នកគ្មានជំនឿក្រៀមក្រំកើតទុក្ខសោក។
25 ដោយពួកគេគិតយ៉ាងច្បាស់ថាគេនឹងទទួលនូវទារុណកម្មយ៉ាងធ្ងន់ធ្ងរ។

كَلَّآ إِذَا بَلَغَتِ ٱلتَّرَاقِيَ ﴿٢٦﴾ وَقِيلَ مَنۡۜ رَاقٖ ﴿٢٧﴾ وَظَنَّ أَنَّهُ ٱلۡفِرَاقُ ﴿٢٨﴾ وَٱلۡتَفَّتِ ٱلسَّاقُ بِٱلسَّاقِ ﴿٢٩﴾
إِلَىٰ رَبِّكَ يَوۡمَئِذٍ ٱلۡمَسَاقُ ﴿٣٠﴾ فَلَا صَدَّقَ وَلَا صَلَّىٰ ﴿٣١﴾ وَلَٰكِن كَذَّبَ وَتَوَلَّىٰ ﴿٣٢﴾ ثُمَّ ذَهَبَ إِلَىٰٓ
أَهۡلِهِۦ يَتَمَطَّىٰٓ ﴿٣٣﴾ أَوۡلَىٰ لَكَ فَأَوۡلَىٰ ﴿٣٤﴾ ثُمَّ أَوۡلَىٰ لَكَ فَأَوۡلَىٰٓ ﴿٣٥﴾ أَيَحۡسَبُ ٱلۡإِنسَٰنُ أَن يُتۡرَكَ
سُدًى ﴿٣٦﴾ أَلَمۡ يَكُ نُطۡفَةٗ مِّن مَّنِيّٖ يُمۡنَىٰ ﴿٣٧﴾ ثُمَّ كَانَ عَلَقَةٗ فَخَلَقَ فَسَوَّىٰ ﴿٣٨﴾ فَجَعَلَ
مِنۡهُ ٱلزَّوۡجَيۡنِ ٱلذَّكَرَ وَٱلۡأُنثَىٰٓ ﴿٣٩﴾ أَلَيۡسَ ذَٰلِكَ بِقَٰدِرٍ عَلَىٰٓ أَن يُحۡـِۧيَ ٱلۡمَوۡتَىٰ ﴿٤٠﴾

26 មិនដូចអ្វីដែលពួកគ្មានជំនឿគិតឡើយថានៅពេលដែលពួកគេស្លាប់ពួកគេមិន
ត្រូវទទួលទារុណកម្មឡើយ។នៅពេលដែលវិញ្ញាណបានមកដល់បំពង់ក។
27 មនុស្សបាននិយាយទៅកាន់គ្នាថា៖តើមាននរណាអាចព្យាបាលគេបាន?
28 ហើយគេបានដឹងខ្លួនឯងច្បាស់ថាគេដល់ពេលត្រូវលាចាកលោកិយហើយ។
29 ស្ថានភាពលំបាកបានប្រមូលផ្តុំនៅចុងក្រោយនៃលោកិយនិងពេលចាប់ផ្តើមនៃ
ថ្ងៃបរលោក។
30 ក្រោយពេលគេដកវិញ្ញាណរួចគេនាំវិញ្ញាណនោះទៅកាន់ព្រះជាម្ចាស់របស់គេ។
31 ហើយពួកគ្មានជំនឿមិនបានជឿលើអ្នកនាំសារនិងមិនបានថ្វាយបង្គំទៅចំ




ពោះអល់ឡោះឡើយ។
(32) ក៏ប៉ុន្តែគេបានបដិសេធនឹងអ្វីដែលអ្នកនាំសារបាននាំមកនិងបានបែរចេញពីការពិត។
(33) បន្ទាប់មកពួកគ្មានជំនឿបានទៅជួបជុំគ្រួសាររបស់គេដោយក្រអឺតក្រទមនិងអួតអាង។
(34) វិនាសអន្តរាយហើយអ្នកគ្មានជំនឿវិនាសអន្តរាយហើយអ្នកគ្មានជំនឿ។
(35) អល់ឡោះបានបញ្ជាក់ម្តងទៀត៖វិនាសអន្តរាយហើយអ្នកគ្មានជំនឿវិនាសអន្តរាយហើយអ្នកគ្មានជំនឿ។
(36) តើមនុស្សលោកនឹកស្មានថា៖អល់ឡោះបោះបង់ចោលពួកគេដោយមិនបង្គាប់ប្រើឱ្យធ្វើអ្វីឬ?
(37) តើមនុស្សមិនបានកើតមកពីទឹកកាមមួយតំណក់ដែលចូលទៅក្នុងស្បូនម្តាយរបស់គេទេឬ?
(38) បន្ទាប់មកគេក៏ក្លាយទៅជាដុំឈាមហើយទ្រង់បានបង្កើតវារួចក៏ធ្វើឱ្យមានរូបរាងពេញលក្ខណៈ។
(39) ក្រោយមកទ្រង់បានបង្កើតអំពីវាជាពីរភេទមានភេទប្រុសនិងភេទស្រី។
(40) តើនោះមិនមែនជាអ្នកដែលមានលទ្ធភាពគ្រប់គ្រាន់ក្នុងការធ្វើឱ្យមនុស្សស្លាប់រស់ឡើងវិញដើម្បីជំនុំជំរះទេឬ?ផ្ទុយទៅវិញទ្រង់ពិតជាមានលទ្ធភាពគ្រប់គ្រាន់។

## អាល់អ៊ិនសាន

**គោលបំណងនៃស៊ូរ៉ោះ**

រំលឹកមនុស្សលោកពីដើមកំណើតរបស់គេនិងមូលហេតុដែលបង្កើតពួកគេហើយនិងមាគ៌ារបស់ពួកគេនៅក្នុងភពទាំង២(ផែនដីនិងបរលោក)និងបង្ហើញពីលាភសក្ការៈក្នុងឋានសួគ៌ដើម្បីអ្នកមានជំនឿមានភាពនឹងនរនិងអំពាវនាវដល់ពួកគ្មានជំនឿ។

**តាហ្សៀរ**

هَلۡ أَتَىٰ عَلَى ٱلۡإِنسَٰنِ حِينٞ مِّنَ ٱلدَّهۡرِ لَمۡ يَكُن شَيۡـٔٗا مَّذۡكُورًا ﴿١﴾ إِنَّا خَلَقۡنَا ٱلۡإِنسَٰنَ مِن نُّطۡفَةٍ
أَمۡشَاجٖ نَّبۡتَلِيهِ فَجَعَلۡنَٰهُ سَمِيعَۢا بَصِيرًا ﴿٢﴾ إِنَّا هَدَيۡنَٰهُ ٱلسَّبِيلَ إِمَّا شَاكِرٗا وَإِمَّا كَفُورًا ﴿٣﴾

(1) ជាការពិតណាស់រយៈពេលដ៏យូរបានកន្លងផុតពីមនុស្សលោកខណៈដែលមនុស្សលោកពុំទាន់កើតមានឡើងដែលគេមិនដឹងថាវាជាអ្វីសោះនោះ។
(2) ពិតប្រាកដណាស់យើងបានបង្កើតមនុស្សលោកអំពីតំណក់ទឹកកាមដែលលាយចូលគ្នារវាងទឹកកាមបុរសនិងទឹកកាមស្ត្រីដើម្បីយើងនឹងសាកល្បងគេនូវអ្វីដែលយើងបានបង្គាប់ប្រើ។រួចមកយើងបានធ្វើឱ្យគេស្តាប់ឮនិងមើលឃើញដើម្បីឱ្យពួកគេអនុវត្តនូវអ្វីដែលយើងបានដាក់ជាច្បាប់លើពួកគេ។
(3) ពិតប្រាកដណាស់យើងបានចង្អុលបង្ហាញគេនូវមាគ៌ាដ៏ត្រឹមត្រូវតាមរយៈពាក្យសុម្ពីរបស់អ្នកនាំសាររបស់យើងដើម្បីឱ្យពួកគេដឹងថាតើនោះគឺជាមាគ៌ាវង្វេង។ហើយបន្ទាប់ពីនោះពួកគេអាចទទួលបានការចង្អុលបង្ហាញលើមាគ៌ាដ៏ត្រឹមត្រូវនឹងក្លាយជាខ្ញុំបម្រើដែលមានជំនឿនិងជាអ្នកដឹងគុណទៅចំពោះអល់ឡោះឬពួកគេអាចវង្វេងចេញពីវានឹងក្លាយជាខ្ញុំបម្រើដែលគ្មានជំនឿនិងជាអ្នករមិលគុណចំពោះអល់ឡោះ។

**បន្ទាប់ពីអល់ឡោះបានប្រាប់ពីប្រភេទទាំងពីរនៃអ្នកចង្អុលបង្ហាញនិងអ្នកវង្វេងអល់ឡោះបានបញ្ជាក់ពីរលទ្ធផលរបស់វាទាំងពីរ។**

إِنَّآ أَعۡتَدۡنَا لِلۡكَٰفِرِينَ سَلَٰسِلَاْ وَأَغۡلَٰلٗا وَسَعِيرًا ﴿٤﴾ إِنَّ ٱلۡأَبۡرَارَ يَشۡرَبُونَ مِن كَأۡسٖ كَانَ مِزَاجُهَا كَافُورًا
﴿٥﴾ عَيۡنٗا يَشۡرَبُ بِهَا عِبَادُ ٱللَّهِ يُفَجِّرُونَهَا تَفۡجِيرٗا ﴿٦﴾ يُوفُونَ بِٱلنَّذۡرِ وَيَخَافُونَ يَوۡمٗا كَانَ شَرُّهُۥ



مُسْتَطِيرًا ۝٧ وَيُطْعِمُونَ ٱلطَّعَامَ عَلَىٰ حُبِّهِۦ مِسْكِينًا وَيَتِيمًا وَأَسِيرًا ۝٨ إِنَّمَا نُطْعِمُكُمْ لِوَجْهِ ٱللَّهِ
لَا نُرِيدُ مِنكُمْ جَزَآءً وَلَا شُكُورًا ۝٩ إِنَّا نَخَافُ مِن رَّبِّنَا يَوْمًا عَبُوسًا قَمْطَرِيرًا ۝١٠ فَوَقَىٰهُمُ ٱللَّهُ شَرَّ
ذَٰلِكَ ٱلْيَوْمِ وَلَقَّىٰهُمْ نَضْرَةً وَسُرُورًا ۝١١ وَجَزَىٰهُم بِمَا صَبَرُوا۟ جَنَّةً وَحَرِيرًا ۝١٢

(4) ពិតប្រាកដណាស់យើងបានរៀបចំសម្រាប់ពួកដែលប្រឆាំងនឹងអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់នូវច្រវាក់ដែកអូសពួកគេចូលនរកនិងខ្នោះសម្រាប់ដាក់ភ្ជាប់នៅក្នុងនរកនិងភ្លើងនរកដែលឆេះយ៉ាងសន្ធោសន្ធៅ។

(5) ពិតប្រាកដណាស់បណ្ដាអ្នកដែលសាងអំពើល្អគឺពួកគេទទួលទានស្រាដែលលាយជាមួយវាអំពីទឹកក្រអូបនៅក្នុងថ្ងៃបរលោក។

(6) នេះជាទឹកសម្រាប់ក្រុមដែលគោរពតាមហើយវាជាប្រភពទឹកងាយស្រួលទទួលទានដែលអល់ឡោះបានផ្ដល់ឱ្យពួកគេនៅក្នុងឋានសួគ៌ពួកគេអាចប្រើប្រាស់វាតាមចំណង់ចិត្ត។

(7) លក្ខណៈសម្បត្តិអ្នកដែលបានពិសារទឹកនោះគឺពួកគេបានបំពេញនូវការតួពកិច្ចដែលពួកគេបានប្ដេជ្ញា(ក្នុងការប្រតិបត្តិតាមអល់ឡោះ)ហើយពួកគេកោតខ្លាចថ្ងៃមួយដែលទារុណកម្មរបស់វារីករាលដាលគ្របទឹកន្លែងវាគឺថ្ងៃបរលោក។

(8) ហើយពួកគេផ្ដល់ចំណីអាហារដែលពួកគេចូលចិត្តនិងត្រូវការទៅដល់ជនក្រីក្រនិងកូនកំព្រាហើយនិងឈ្លើយសឹក។

(9) ពួកគេមានក្ដីសប្បាយរីករាយក្នុងខ្លួនរបស់ពួកគេ។ជាការពិតណាស់ពួកគេមិនបានផ្ដល់ចំណីអាហារដល់ពួកអ្នកទាំងនោះឡើយលើកលែងតែធ្វើដើម្បីអល់ឡោះប៉ុណ្ណោះដោយពួកគេមិនចង់បានការតបស្នងនិងគុណបំណាច់អ្វីពីពួកអ្នកទាំងនោះឡើយ។

(10) ពិតប្រាកដណាស់ពួកយើងកោតខ្លាចម្ចាស់របស់ពួកយើងនៅថ្ងៃមួយដែលម្នាក់ៗមុខក្រញូវដោយសារភាពភ័យខ្លាចនិងក្ដីរន្ធត់នៅថ្ងៃនោះ។

(11) អល់ឡោះបានការពារពួកគេពីគ្រោះអាក្រក់នៃ ថ្ងៃនោះហើយបានប្រទានឱ្យពួកគេនូវពន្លឺដ៏ត្រចះត្រចង់នៅលើមុខរបស់ពួកគេនិងសេចក្ដីរីករាយក្នុងចិត្តពួកគេទៀតផង។

(12) ហើយទ្រង់បានតបស្នងដល់ពួកគេនូវឋានសួគ៌និងសំលៀកបំពាក់ដែលធ្វើអំពីសូត្រដោយសារការអត់ធ្មត់របស់ពួកគេក្នុងការអនុវត្តតាមបទបញ្ជានិង ការកំណត់របស់អល់ឡោះនិងការអត់ធ្មត់របស់ពួកគេពីការមិនប្រព្រឹត្តអាបាយមុខ។

مُّتَّكِـِٔينَ فِيهَا عَلَى ٱلْأَرَآئِكِ لَا يَرَوْنَ فِيهَا شَمْسًا وَلَا زَمْهَرِيرًا ۝١٣ وَدَانِيَةً عَلَيْهِمْ ظِلَـٰلُهَا وَذُلِّلَتْ
قُطُوفُهَا تَذْلِيلًا ۝١٤ وَيُطَافُ عَلَيْهِم بِـَٔانِيَةٍ مِّن فِضَّةٍ وَأَكْوَابٍ كَانَتْ قَوَارِيرَا۠ ۝١٥ قَوَارِيرَا۟ مِن فِضَّةٍ
قَدَّرُوهَا تَقْدِيرًا ۝١٦ وَيُسْقَوْنَ فِيهَا كَأْسًا كَانَ مِزَاجُهَا زَنجَبِيلًا ۝١٧ عَيْنًا فِيهَا تُسَمَّىٰ سَلْسَبِيلًا ۝١٨
وَيَطُوفُ عَلَيْهِمْ وِلْدَٰنٌ مُّخَلَّدُونَ إِذَا رَأَيْتَهُمْ حَسِبْتَهُمْ لُؤْلُؤًا مَّنثُورًا ۝١٩ وَإِذَا رَأَيْتَ ثَمَّ رَأَيْتَ نَعِيمًا
وَمُلْكًا كَبِيرًا ۝٢٠ عَـٰلِيَهُمْ ثِيَابُ سُندُسٍ خُضْرٌ وَإِسْتَبْرَقٌ وَحُلُّوٓا۟ أَسَاوِرَ مِن فِضَّةٍ وَسَقَىٰهُمْ
رَبُّهُمْ شَرَابًا طَهُورًا ۝٢١ إِنَّ هَـٰذَا كَانَ لَكُمْ جَزَآءً وَكَانَ سَعْيُكُم مَّشْكُورًا ۝٢٢

(13) ដោយពួកគេអង្គុយផ្អែកនៅលើកៅអីដែលតុបតែងយ៉ាងស្រស់ស្អាត់នៅក្នុងឋានសួគ៌នោះ។នៅក្នុងនោះពួកគេមិនត្រូវកំដៅព្រះអាទិត្យឡើយហើយក៏មិនត្រជាក់ខ្លាំងដែរ។ផ្ទុយទៅវិញពួកគេនៅក្នុងម្លប់ហួតមិនក្ដៅហើយក៏មិនត្រជាក់ដែរ។





14 ហើយម្លប់ដើមឈើរបស់វានៅជិតពួកគេហើយផ្លែឈើរបស់វាត្រូវគេធ្វើឱ្យងាយ
ស្រួលបេះបំផុត។ងាយស្រួលសម្រាប់អ្នកដែលចង់បេះយកមកបរិភោគពួកគេអាច
ដេកបេះក៏បានអង្គុយបេះក៏បានឈរបេះក៏បាន។
15 ហើយមានអ្នកបម្រើដើរជុំវិញពួកគេដោយមានគ្រឿងភាជន៍ដែលធ្វើអំពីប្រាក់និង
ពែងថ្មកែវភ្លឺផ្លេកនៅពេលដែលពួកគេត្រូវការពិសារ។
16 វាថ្លាដូចកញ្ចក់គ្រាន់តែវាធ្វើអំពីប្រាក់ដែលត្រូវបានកំណត់វាយ៉ាងសមល្មមមិន
ពេកហើយក៏មិនតូចដែរសម្រាប់ទទួលទានតាមចំណង់ចិត្តរបស់ពួកគេ។
17 ហើយពួកអ្នកដែលថ្កុំថ្កើងនោះត្រូវបានគេឱ្យទទួលទានស្រាដែលលាយជាមួយវា
នូវរសជាតិខ្ញី។
18 ប្រភពស្រានៅក្នុងឋានសួគ៌នោះគេឱ្យឈ្មោះថា៖សាល់សាប៊ីល។
19 ហើយក្មេងៗដែលនៅវ័យក្មេងជាអមតៈដើរជុំវិញរង់ចាំបម្រើពួកគេ។នៅពេល
ដែលអ្នក(មូហាំម៉ាត់)ឃើញពួកគេអ្នកនឹងគិតថាពួកគេជាគជ់ខ្យងដ៏ភ្លឺចែងចាំង
ដោយសារភាពស្រស់ស្អាតនឹងសម្បុរដ៏ស្រស់ថ្លានិងទឹកមុខស្រស់បស់របស់ពួកគេ។
20 ហើយនៅពេលដែលអ្នក(មូហាំម៉ាត់)ក្រឡេកមើលទៅទីនោះ(ឋានសួគ៌)អ្នក
នឹងឃើញនៀកម៉ាត់គ្រប់បែបយ៉ាងដែលអ្នកនឹកស្មានមិនដល់និងអំណាចដ៏ធំធេង
មិនអាចគណនាបាន។
21 នៅពីលើខ្លួនប្រាណរបស់ពួកគេគឺសំលៀកបំពាក់ធ្វើអំពីសូត្រម៉ដ្ឋខៀវនិងសូត្រ
ក្រាស់ពណ៌បៃតង។ហើយពួកគេត្រូវបានគេបំពាក់កងដៃប្រាក់។ហើយម្ចាស់របស់
ពួកគេបានប្រទានឱ្យពួកគេនូវភេសជ្ជៈដ៏បរិសុទ្ធ ។
22 គេបាននិយាយទៅកាន់ពួកគេដោយលើកដំកើងថា៖ពិតប្រាកដណាស់នៀក
ម៉ាត់នេះគឺជាការតបស្នងសម្រាប់ពួកអ្នកវាជាផលបុណ្យរបស់ពួកអ្នកលើទង្វើល្អ
របស់ពួកអ្នកហើយការខំប្រឹងប្រែងរបស់ពួកអ្នកត្រូវបានអល់ឡោះទទួលយក។

إِنَّا نَحۡنُ نَزَّلۡنَا عَلَيۡكَ ٱلۡقُرۡءَانَ تَنزِيلٗا ٢٣ فَٱصۡبِرۡ لِحُكۡمِ رَبِّكَ وَلَا تُطِعۡ مِنۡهُمۡ ءَاثِمًا أَوۡ
كَفُورٗا ٢٤ وَٱذۡكُرِ ٱسۡمَ رَبِّكَ بُكۡرَةٗ وَأَصِيلٗا ٢٥ وَمِنَ ٱلَّيۡلِ فَٱسۡجُدۡ لَهُۥ وَسَبِّحۡهُ لَيۡلٗا
طَوِيلًا ٢٦ إِنَّ هَٰٓؤُلَآءِ يُحِبُّونَ ٱلۡعَاجِلَةَ وَيَذَرُونَ وَرَآءَهُمۡ يَوۡمٗا ثَقِيلٗا ٢٧ نَّحۡنُ خَلَقۡنَٰهُمۡ
وَشَدَدۡنَآ أَسۡرَهُمۡۖ وَإِذَا شِئۡنَا بَدَّلۡنَآ أَمۡثَٰلَهُمۡ تَبۡدِيلًا ٢٨ إِنَّ هَٰذِهِۦ تَذۡكِرَةٞۖ فَمَن شَآءَ ٱتَّخَذَ
إِلَىٰ رَبِّهِۦ سَبِيلٗا ٢٩ وَمَا تَشَآءُونَ إِلَّآ أَن يَشَآءَ ٱللَّهُۚ إِنَّ ٱللَّهَ كَانَ عَلِيمًا حَكِيمٗا
٣٠ يُدۡخِلُ مَن يَشَآءُ فِي رَحۡمَتِهِۦۚ وَٱلظَّٰلِمِينَ أَعَدَّ لَهُمۡ عَذَابًا أَلِيمَۢا ٣١

23 ពិតប្រាកដណាស់យើងបានបញ្ចុះគម្ពីរគួរអានឱ្យអ្នក(ម៉ូហាំម៉ាត់)ជាដំណាក់កា
លៗ។យើងមិនបានបញ្ចុះវាម្តងទាំងអស់នោះទេ។
24 ចូរអ្នក(មូហាំម៉ាត់)អត់ធ្មត់ចំពោះបទបញ្ញត្តិនៃ ម្ចាស់របស់អ្នកហើយកុំប្រតិបត្តិ
តាមអ្នកដែលប្រព្រឹត្តបាបកម្មឬអ្នកប្រឆាំងក្នុងចំណោមពួកគេឱ្យសោះ។
25 ចូរប្រតិបត្តិសឡាតចំពោះម្ចាស់របស់អ្នកនៅពេលព្រឹកសឡាត់ហ្វាជរ៍និងសឡាត់
ហ្ស៊ូហ៊្រនិងអាស៊ើរនៅពេលល្ងាច។
26 ចូររំលឹកទៅចំពោះទ្រង់ដោយសឡាតទាំង២៖សឡាតម៉ាគរិបនិងសឡាត់អ៊ីសើ
ហើយចូរស៊ូជូត(ថ្វាយបង្គំ)ចំពោះទ្រង់និងលើកតម្កើងទ្រង់បន្ទាប់ពីវាទាំងពីរ។
27 ពិតប្រាកដណាស់ពួកទាំងនោះ(ពួកមូស្ហរីគីន)ស្រឡាញ់ការរស់នៅក្នុង
លោកិយនិងយកចិត្តទុកដាក់លើវាហើយពួកគេបោះបង់ថ្ងៃដែលមានភាពរឹកររដ៏ខ្លាំង



ក្លា(ថ្ងៃបរលោក)ដាក់ក្រោយខ្នងរបស់ពួកគេ។
28 យើងគឺជាអ្នកដែលបានបង្កើតពួកគេនិងបានពង្រឹងរាងកាយរបស់ពួកគេ។តែបើ
យើងមានចេតនាចង់បំផ្លាញពួកគេយើងក៏អាចផ្លាស់ប្តូរក្រុមផ្សេងទៀតដូចពួកគេមក
ជំនួសវិញបានដែរ។
29 ពិតប្រាកដណាស់ជំពូកនេះគឺជាការដាស់តឿននិងការរំលឹកមួយ។ដូច្នេះអ្នកណាហើយ
ប្រាថ្នាចង់បានល្អនោះគេពិតជាជ្រើសរើសមាគ៌ាទៅកាន់ម្ចាស់របស់គេជាមិនខាន។
30 ហើយពួកអ្នកមិនអាចមានបំណងធ្វើអ្វីមួយបានឡើយលើកលែងតែអល់ឡោះ
មានចេតនាប៉ុណ្ណោះ។ពិតប្រាកដណាស់អល់ឡោះមហាដឹងមហាគតិបណ្ឌិត។
31 ដោយទ្រង់នឹងបញ្ចូលទៅក្នុងក្តីមេត្តាករុណារបស់ទ្រង់ចំពោះអ្នកណាដែលទ្រង់
មានចេតនា។ហើយពួកដែលបំពានទ្រង់បានរៀបចំសម្រាប់ពួកគេនូវទារុណកម្មដ៏
សែនឈឺចាប់។

## អាល់មួរសីឡាត

**គោលបំណងនៃស៊ូរ៉ោះ**

បញ្ជាក់ពីការមានពិតនៃថ្ងៃបរលោកតាមរយៈភស្តុតាងដែលពួកអ្នកប្រឆាំងទាមទារ
ហើយភ្ជាប់មកជាមួយវាផងដែលនូវការព្រមាននិងការគំរាមកំហែង។

**តាហ្វសៀរ**

وَٱلۡمُرۡسَلَٰتِ عُرۡفٗا ١ فَٱلۡعَٰصِفَٰتِ عَصۡفٗا ٢ وَٱلنَّٰشِرَٰتِ نَشۡرٗا ٣ فَٱلۡفَٰرِقَٰتِ فَرۡقٗا ٤
فَٱلۡمُلۡقِيَٰتِ ذِكۡرًا ٥ عُذۡرًا أَوۡ نُذۡرًا ٦ إِنَّمَا تُوعَدُونَ لَوَٰقِعٞ ٧ فَإِذَا ٱلنُّجُومُ طُمِسَتۡ ٨
وَإِذَا ٱلسَّمَآءُ فُرِجَتۡ ٩ وَإِذَا ٱلۡجِبَالُ نُسِفَتۡ ١٠ وَإِذَا ٱلرُّسُلُ أُقِّتَتۡ ١١ لِأَيِّ يَوۡمٍ أُجِّلَتۡ ١٢
لِيَوۡمِ ٱلۡفَصۡلِ ١٣ وَمَآ أَدۡرَىٰكَ مَا يَوۡمُ ٱلۡفَصۡلِ ١٤ وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ

1 អល់ឡោះស្បថនឹងខ្យល់(ឬម៉ាឡាអ៊ីកាត់)ដែលត្រូវគេបញ្ជូនមកជាបន្តបន្ទាប់។
2 អល់ឡោះស្បថនឹងខ្យល់ព្យុះដ៏ខ្លាំងក្លា។
3 អល់ឡោះស្បថនឹងខ្យល់ដែលពង្រាយទឹកភ្លៀង។
4 អល់ឡោះស្បថនឹងម៉ាឡាអ៊ីកាត់ដែលបែងចែកនូវប្រការពិតនិងប្រការមិនពិត។
5 អល់ឡោះស្បថនឹងម៉ាឡាអ៊ីកាត់ដែលនាំសារមកឱ្យបណ្តាអ្នកនាំសារ។
6 គេបាននាំមកនូវវាហ៊ីជាការអត់ឱនពីអល់ឡោះចំពោះមនុស្សលោកហើយ
ដាស់តឿនពួកគេឱ្យប្រុងប្រយ័ត្នចំពោះទារុណកម្មរបស់ទ្រង់។
7 ពិតប្រាកដណាស់អ្វីដែលគេសន្យាអំពីការបង្កើតឡើងវិញការជំនុំជំរះនិងការតប
ស្នងនឹងកើតឡើងយ៉ាងពិតប្រាកដ។
8 បន្ទាប់មកនៅពេលដែលផ្កាយទាំងឡាយត្រូវគេបំបាត់ពន្លឺរបស់វាហើយពន្លឺរបស់
វាបានបាត់បង់ទាំងស្រុង។
9 នៅពេលដែលមេឃត្រូវប្រេះបែកហើយម៉ាឡាអ៊ីកាត់បានចុះមក។
10 ហើយនៅពេលដែលភ្នំត្រូវគេធ្វើឱ្យផ្ទុះបើងខ្ទេចខ្ទីពីកន្លែងរបស់វា។
11 ហើយនៅពេលដែលបណ្តាអ្នកនាំសារត្រូវគេប្រមូលតាមកាលកំណត់។
12 សម្រាប់ថ្ងៃដ៏មហិមាពួកគាត់ត្រូវមានវត្តមាននៅថ្ងៃនេះដើម្បីធ្វើសាក្សីលើប្រជា
ជាតិរបស់ពួកគាត់។
13 សម្រាប់ថ្ងៃកាត់ក្តីរវាងមនុស្សលោកតាមអំពើរបស់ពួកគេហើយពួកគេត្រូវបំបែក
ជាពីរមួយក្រុមទៅឋានសួគ៌និងមួយក្រុមទៅឋាននរក។





14 តើអ្វីដែលធ្វើឱ្យអ្នក(ម៉ូហាំម៉ាត់)ដឹងថាថ្ងៃវិនិច្ឆ័យជាអ្វីនោះ ?
15 នៅថ្ងៃនោះការវិនាសអន្តរាយគឺសម្រាប់ពួកដែល បដិសេធនឹងការពិតបដិសេធនឹង
អ្វីដែលអល់ឡោះបានផ្តល់ឱ្យអ្នកនាំសាររបស់ទ្រង់។

أَلَمۡ نُهۡلِكِ ٱلۡأَوَّلِينَ ﴿١٦﴾ ثُمَّ نُتۡبِعُهُمُ ٱلۡأٓخِرِينَ ﴿١٧﴾ كَذَٰلِكَ نَفۡعَلُ بِٱلۡمُجۡرِمِينَ ﴿١٨﴾ وَيۡلٞ يَوۡمَئِذٖ
لِّلۡمُكَذِّبِينَ ﴿١٩﴾ أَلَمۡ نَخۡلُقكُّم مِّن مَّآءٖ مَّهِينٖ ﴿٢٠﴾ فَجَعَلۡنَٰهُ فِي قَرَارٖ مَّكِينٍ ﴿٢١﴾ إِلَىٰ قَدَرٖ مَّعۡلُومٖ ﴿٢٢﴾
فَقَدَرۡنَا فَنِعۡمَ ٱلۡقَٰدِرُونَ ﴿٢٣﴾ وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٢٤﴾ أَلَمۡ نَجۡعَلِ ٱلۡأَرۡضَ كِفَاتًا ﴿٢٥﴾ أَحۡيَآءٗ وَأَمۡوَٰتٗا ﴿٢٦﴾
وَجَعَلۡنَا فِيهَا رَوَٰسِيَ شَٰمِخَٰتٖ وَأَسۡقَيۡنَٰكُم مَّآءٗ فُرَاتٗا ﴿٢٧﴾ وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٢٨﴾

16 តើមិនមែនទេឬយើងបានបំផ្លាញពួកកាហ្វៀរនៃប្រជាជាតិសម័យមុនដោយសារ
តែពួកគេមិនជឿចំពោះពួករ៉សូលរបស់ពួកគេនោះ ?
17 បន្ទាប់មកពួកជំនាន់ក្រោយក៏បានធ្វើដូចពួកគេហើយយើងក៏បានបំផ្លាញពួកគេ
ដូចពួកអ្នកមុនដែរ។
18 ដូច្នេះដែរយើងធ្វើទៅលើពួកប្រព្រឹត្តបាបកម្មពួកបដិសេធនឹងអ្វីដែលអ្នកនាំសារ
ម៉ូហាំម៉ាត់បាននាំមក។
19 នៅថ្ងៃនោះការវិនាសអន្តរាយទារុណកម្មគឺសម្រាប់ពួកដែលបដិសេធនឹងការ
សន្យារបស់អល់ឡោះលើការដាក់ទារុណកម្មលើពួកប្រព្រឹត្តបាបកម្ម។
20 តើមិនមែនទេឬយើងបានបង្កើតពួកអ្នកពីធាតុទឹកដ៏ទន់ខ្សោយបំផុតគឺទឹកកាម។
21 យើងបានដាក់វាទៅកន្លែងដ៏មានសុវត្ថិភាពគឺនៅក្នុងស្បូនមនុស្សស្រី។
22 មានរយៈកាលកំណត់មួយគឺរយៈពេលនៃការមានទម្ងន់។
23 យើងបានកំណត់លក្ខណសម្បត្តិរបស់ទារកនិងបានកំណត់ពណ៌សំបុរគេនិង
អ្វីផ្សេងទៀត។អ្នកដែលកំណត់ក្រឹត្យក្រមដ៏ប្រសើរបំផុតគឺអល់ឡោះជាម្ចាស់។
24 នៅថ្ងៃនោះការវិនាសអន្តរាយទារុណកម្មគឺសម្រាប់ពួកដែលបដិសេធនឹងការ
សន្យារបស់អល់ឡោះលើការដាក់ទារុណកម្មលើពួកប្រព្រឹត្តបាបកម្ម។
25 តើមិនមែនទេឬយើងបានបង្កើតផែនដីជាកន្លែងសម្រាប់ប្រមូលផ្តុំមនុស្សទាំង
ឡាយ។
26 ទាំងមនុស្សរស់ឱ្យមានជាលំនៅឋានស្នាក់នៅលើវានិងអ្នកស្លាប់ត្រូវបានគេកប់
នៅក្នុងផ្ទៃ។
27 ហើយយើងបានបង្កើតភ្នំខ្ពស់ៗនៅលើវាដើម្បីទប់លំនឹងនិងបានផ្តល់ទឹកបរិសុទ្ធ
ឱ្យពួកអ្នក។ហើយអ្នកដែលបានបង្កើតអ្វីៗទាំងនេះមិនអសមត្ថភាពបង្កើតពួកអ្នក
ឡើងវិញឡើយ។
28 នៅថ្ងៃនោះការវិនាសអន្តរាយទារុណកម្មគឺសម្រាប់ពួកដែលបដិសេធនឹងការ
សន្យារបស់អល់ឡោះលើការដាក់ទារុណកម្មលើពួកប្រព្រឹត្តបាបកម្ម។

ٱنطَلِقُوٓاْ إِلَىٰ مَا كُنتُم بِهِۦ تُكَذِّبُونَ ﴿٢٩﴾ ٱنطَلِقُوٓاْ إِلَىٰ ظِلّٖ ذِي ثَلَٰثِ شُعَبٖ ﴿٣٠﴾ لَّا ظَلِيلٖ وَلَا يُغۡنِي مِنَ
ٱللَّهَبِ ﴿٣١﴾ إِنَّهَا تَرۡمِي بِشَرَرٖ كَٱلۡقَصۡرِ ﴿٣٢﴾ كَأَنَّهُۥ جِمَٰلَتٞ صُفۡرٞ ﴿٣٣﴾ وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٣٤﴾
هَٰذَا يَوۡمُ لَا يَنطِقُونَ ﴿٣٥﴾ وَلَا يُؤۡذَنُ لَهُمۡ فَيَعۡتَذِرُونَ ﴿٣٦﴾ وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٣٧﴾ هَٰذَا يَوۡمُ ٱلۡفَصۡلِ
جَمَعۡنَٰكُمۡ وَٱلۡأَوَّلِينَ ﴿٣٨﴾ فَإِن كَانَ لَكُمۡ كَيۡدٞ فَكِيدُونِ ﴿٣٩﴾ وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٤٠﴾

29 គេនិយាយទៅកាន់ពួកដែលបដិសេធនឹងអ្វីដែលអ្នកនាំសារពួកគេបាននាំមកថា
ចូរពួកអ្នកនាំគ្នាទៅចុះទៅកាន់អ្វីដែលពួកអ្នកធ្លាប់បានបដិសេធ។





30 ចូរនាំគ្នាទៅកាន់ម្លប់ផ្សែងនៃភ្លើងនរកដែលកំពុងឆាបឆេះហើយផ្សែងនោះបែកទៅជាបីផ្នែក។
31 មិនមានម្លប់ត្រជាក់ហើយក៏គ្មានអ្វីអាចរារាំងពីកម្តៅភ្លើងនរកដែរ។
32 ភ្លើងនរកនេះវាជះផ្កាភ្លើងរាល់ផ្កាភ្លើងរបស់វានីមួយៗមានទំហំប៉ុនមហាវិមានដ៏ធំស្កឹមស្កៃ។
33 ផ្កាភ្លើងនោះនៅពេលវាផ្ទុះប៉ើងហើយធ្លាក់មកនៅសល់កម្ទេចកម្ទីរបស់វាមានទំហំប៉ុនសត្វអូដ្ឋពណ៌ខ្មៅ។
34 នៅថ្ងៃនោះការវិនាសអន្តរាយទារុណកម្មគឺសម្រាប់ពួកដែលបដិសេធនឹងការសន្យារបស់អល់ឡោះលើការដាក់ទារុណកម្មលើពួកប្រព្រឹត្តបាបកម្ម។
35 នេះគឺជាថ្ងៃដែលពួកគេមិនអាចនិយាយបានឡើយ។
36 ហើយពួកគេមិនត្រូវគេអនុញ្ញាតឱ្យនិយាយដោះសាពីការប្រឆាំងនិងទង្វើអាក្រក់របស់ពួកគេបានឡើយ។
37 នៅថ្ងៃនោះការវិនាសអន្តរាយទារុណកម្មគឺសម្រាប់ពួកដែលបដិសេធនឹងការសន្យារបស់អល់ឡោះលើការដាក់ទារុណកម្មលើពួកប្រព្រឹត្តបាបកម្ម។
38 នេះហើយគឺជាថ្ងៃកាត់សេចក្តីរវាងមនុស្សលោកដែលយើងបានប្រមូលពួកអ្នកនិងពួកជំនាន់មុនក្នុងពេលតែមួយ។
39 ប្រសិនបើពួកអ្នកមានល្បិចកលអ្វីដើម្បីយកឈ្នះពីទារុណកម្មរបស់អល់ឡោះចូរពួកអ្នកបញ្ចេញមកចុះ។
40 នៅថ្ងៃនោះការវិនាសអន្តរាយទារុណកម្មគឺសម្រាប់ពួកដែលបដិសេធនឹងការសន្យារបស់អល់ឡោះលើការដាក់ទារុណកម្មលើពួកប្រព្រឹត្តបាបកម្ម។

إِنَّ ٱلۡمُتَّقِينَ فِي ظِلَٰلٖ وَعُيُونٖ ﴿٤١﴾ وَفَوَٰكِهَ مِمَّا يَشۡتَهُونَ ﴿٤٢﴾ كُلُواْ وَٱشۡرَبُواْ هَنِيٓـَٔۢا بِمَا كُنتُمۡ تَعۡمَلُونَ ﴿٤٣﴾
إِنَّا كَذَٰلِكَ نَجۡزِي ٱلۡمُحۡسِنِينَ ﴿٤٤﴾ وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٤٥﴾ كُلُواْ وَتَمَتَّعُواْ قَلِيلًا إِنَّكُم مُّجۡرِمُونَ
﴿٤٦﴾ وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٤٧﴾ وَإِذَا قِيلَ لَهُمُ ٱرۡكَعُواْ لَا يَرۡكَعُونَ ﴿٤٨﴾
وَيۡلٞ يَوۡمَئِذٖ لِّلۡمُكَذِّبِينَ ﴿٤٩﴾ فَبِأَيِّ حَدِيثِۭ بَعۡدَهُۥ يُؤۡمِنُونَ

41 ពិតប្រាកដណាស់បណ្តាអ្នកដែលកោតខ្លាចអល់ឡោះដោយងនុវត្តតាមបទបញ្ជាទ្រង់ហើយជៀសវាងពីប្រការដែលទ្រង់ហាមឃាត់គឺនៅក្នុងម្លប់ដើមឈើឋានសួគ៌ជាមួយនឹងប្រភពទឹកដ៏ច្រើន។
42 និងមានផ្លែឈើគ្រប់ប្រភេទតាមអ្វីដែលពួកគេប្រាថ្នា។
43 គេនិយាយទៅកាន់ពួកគេថាចូរពួកអ្នកបរិភោគនិងទទួលទានពីរបស់ដែលល្អដោយក្តីរីករាយដោយសារតែអ្វីដែលពួកអ្នកធ្លាប់បានប្រព្រឹត្តទង្វើកុសលកាលនៅលោកិយ។
44 ដូច្នេះដែរយើងពិតជានឹងតបស្នងដល់បណ្តាអ្នកដែលសាងអំពើល្អ។
45 នៅថ្ងៃនោះការវិនាសអន្តរាយទារុណកម្មគឺសម្រាប់ពួកដែលបដិសេធនឹងការសន្យារបស់អល់ឡោះលើការដាក់ទារុណកម្មលើពួកប្រព្រឹត្តបាបកម្ម។
46 គេនិយាយទៅកាន់ពួកបដិសេធថាចូរពួកអ្នកស៊ីចុកនិងរីករាយបន្តិចចុះនៅលើលោកិយនេះពិតណាស់ពួកអ្នកគឺជាឧក្រិដ្ឋជនដោយសារការប្រឆាំងចំពោះអល់ឡោះនិងបដិសេធនឹងអ្នកនាំសារ។
47 នៅថ្ងៃនោះការវិនាសអន្តរាយទារុណកម្មគឺសម្រាប់ពួកដែលបដិសេធនឹងការសន្យារបស់អល់ឡោះលើការដាក់ទារុណកម្មលើពួកប្រព្រឹត្តបាបកម្ម។
48 នៅពេលគេប្រើឱ្យពួកគេសឡាតពួកគេមិនព្រមសឡាតឡើយ។





49 នៅថ្ងៃនោះការវិនាសអន្តរាយទារុណកម្មគឺសម្រាប់ពួកដែលបដិសេធនឹងការ
សន្យារបស់អល់ឡោះលើការដាក់ទារុណកម្មលើពួកប្រព្រឹត្តបាបកម្ម។
50 បើគម្ពីគួរអានដែលបញ្ចុះពីព្រះជាម្ចាស់ពួកគេគ្មានជំនឿតើមានពាក្យអ្វីក្រៅពីវា
ដែលធ្វើឱ្យពួកគេមានជំនឿនោះ?

## អាន់ណាហ្ពាក

**គោលបំណងនៃស៊ូរោះ**ការបញ្ជាក់ពីការបង្កើតឡើងវិញនិងការតបស្នងដោយផ្អែក
លើភាសុត្តតាងយ៉ាងច្បាស់លាស់។

**តាហ្វសៀរ**

عَمَّ يَتَسَآءَلُونَ ﴿١﴾ عَنِ ٱلنَّبَإِ ٱلْعَظِيمِ ﴿٢﴾ ٱلَّذِى هُمْ فِيهِ مُخْتَلِفُونَ ﴿٣﴾ كَلَّا سَيَعْلَمُونَ ﴿٤﴾ ثُمَّ كَلَّا سَيَعْلَمُونَ
﴿٥﴾ أَلَمْ نَجْعَلِ ٱلْأَرْضَ مِهَٰدًا ﴿٦﴾ وَٱلْجِبَالَ أَوْتَادًا ﴿٧﴾ وَخَلَقْنَٰكُمْ أَزْوَٰجًا ﴿٨﴾ وَجَعَلْنَا نَوْمَكُمْ سُبَاتًا ﴿٩﴾
وَجَعَلْنَا ٱلَّيْلَ لِبَاسًا ﴿١٠﴾ وَجَعَلْنَا ٱلنَّهَارَ مَعَاشًا ﴿١١﴾ وَبَنَيْنَا فَوْقَكُمْ سَبْعًا شِدَادًا ﴿١٢﴾ وَجَعَلْنَا سِرَاجًا
وَهَّاجًا ﴿١٣﴾ وَأَنزَلْنَا مِنَ ٱلْمُعْصِرَٰتِ مَآءً ثَجَّاجًا ﴿١٤﴾ لِّنُخْرِجَ بِهِۦ حَبًّا وَنَبَاتًا ﴿١٥﴾ وَجَنَّٰتٍ أَلْفَافًا ﴿١٦﴾

1 តើពួកមុស្ហរីគីនសួរដេញដោលគ្នាអំពីរឿងអ្វី?បន្ទាប់ពីអល់ឡោះបានតែងតាំងមូ៉
ហាំម៉ាត់ជាអ្នកនាំសារ។
2 ពួកគេបានសួរដេញដោលគ្នាអំពីដំណឹងដ៏សំខាន់គឺគម្ពីអាល់គួរអានដែលបញ្ចុះ
មកឱ្យអ្នកនាំសារដែលបានរៀបរាប់ពីដំណឹងនៃការបង្កើតមនុស្ស(បន្ទាប់ពីស្លាប់)ឱ្យ
រស់ឡើងវិញ។
3 ពួកគេខ្វែងគំនិតគ្នាអំពីអាល់គួរអានអ្នកខ្លះថាជាមន្តអាគមអ្នកខ្លះទៀតថាជា
កំណាព្យហើយអ្នកខ្លះទៀតថាជាគ្រូទាយហើយអ្នកខ្លះទៀតថាជារឿងព្រេងនិទាន។
4 មិនដូចអ្វីដែលពួកគេចោទឡើយ។ហើយពួកគេនឹងដឹងពីលទ្ធផលដ៏អាក្រក់
របស់ពួកគេដែលពួកគេបានបដិសេធនឹងគម្ពីគួរអាន។
5 បន្ទាប់មកទ្រង់បានគំរាមកំហែងនិងគម្រាមម្តងហើយម្តងទៀត។
6 តើយើងមិនបានបង្កើតផែនដីឱ្យមានសណ្ឋានរាបស្មើឱ្យពួកគេងាយស្រួលរស់
នៅទេឬ?
7 យើងបានបង្កើតភ្នំជាស្នឹងសម្រាប់ទប់លំនឹងផែនដីកុំឱ្យវារញ្ជួយ។
8 ហើយយើងបានបង្កើតពួកអ្នកជាបុរសនិងស្ត្រី។
9 យើងបានធ្វើឱ្យដំណេករបស់ពួកអ្នកជាការបញ្ឈប់ការធ្វើចលនាដើម្បីសម្រាកកា
យ។
10 យើងបានធ្វើឱ្យភាពងងឹតនៃពេលយប់គ្របដណ្តប់ពួកអ្នកដូចជាសម្លៀកបំពាក់
បាំងគ្របខ្លួនប្រាណពួកអ្នកដែរ។
11 យើងបានធ្វើឱ្យពេលថ្ងៃមានពន្លឺដើម្បីឱ្យពួកគេស្វែងរកកំរៃនិងលាភសក្ការៈ។
12 យើងបានបង្កើតមេឃប្រាំពីរជាន់ដែលជាសំណង់ដ៏រឹងមាំ។
13 យើងបានបង្កើតព្រះអាទិត្យមានរស្មីចែងចាំងនិងកំម្តៅ។
14 ហើយយើងបានបញ្ចុះទឹកភ្លៀងសន្ធឹកសន្ធាប់ពីពពកដែលពោរពេញដោយទឹក
ដែលមិនទាន់ធ្លាក់មកជាទឹកភ្លៀង។
15 ដោយសារទឹកភ្លៀងនេះយើងបង្កើតចេញជាគ្រាប់ធញ្ញជាតិនិងរុក្ខជាតិផ្សេងៗ។
16 បង្កើតជាចំការដែលពោរពេញដោយដើមឈើហូបផ្លែបែកមែកសាខាស្រាក់ចូលគ្នា។

**បន្ទាប់ពីអល់ឡោះបានរៀបរាប់ពីលាភសក្ការៈដែលឆ្លុះបញ្ចាំងពីសមត្ថភាពរបស់ទ្រង់
ហើយទ្រង់ក៏បានផ្ជាប់មកជាមួយនូវការបង្កើតមនុស្សឡើងវិញនិងថ្ងៃបរលោក**



ពីព្រោះអ្នកដែលអាចផ្តល់លាភសក្ការៈនេះពិតជាអាចបង្កើតមនុស្សស្លាប់ឱ្យរស់ឡើង
វិញដើម្បីជំនុំជំរះពួកគេ។

إِنَّ يَوْمَ ٱلْفَصْلِ كَانَ مِيقَـٰتًا ﴿١٧﴾ يَوْمَ يُنفَخُ فِى ٱلصُّورِ فَتَأْتُونَ أَفْوَاجًا ﴿١٨﴾ وَفُتِحَتِ ٱلسَّمَآءُ فَكَانَتْ
أَبْوَٰبًا ﴿١٩﴾ وَسُيِّرَتِ ٱلْجِبَالُ فَكَانَتْ سَرَابًا ﴿٢٠﴾ إِنَّ جَهَنَّمَ كَانَتْ مِرْصَادًا ﴿٢١﴾ لِّلطَّـٰغِينَ مَـَٔابًا ﴿٢٢﴾
لَّـٰبِثِينَ فِيهَآ أَحْقَابًا ﴿٢٣﴾ لَّا يَذُوقُونَ فِيهَا بَرْدًا وَلَا شَرَابًا ﴿٢٤﴾ إِلَّا حَمِيمًا وَغَسَّاقًا ﴿٢٥﴾
جَزَآءً وِفَاقًا ﴿٢٦﴾ إِنَّهُمْ كَانُوا۟ لَا يَرْجُونَ حِسَابًا ﴿٢٧﴾ وَكَذَّبُوا۟ بِـَٔايَـٰتِنَا كِذَّابًا ﴿٢٨﴾
وَكُلَّ شَىْءٍ أَحْصَيْنَـٰهُ كِتَـٰبًا ﴿٢٩﴾ فَذُوقُوا۟ فَلَن نَّزِيدَكُمْ إِلَّا عَذَابًا ﴿٣٠﴾

17 ពិតណាស់ថ្ងៃកាត់ក្តីគឺជាពេលវេលាដែលត្រូវបានគេកំណត់យ៉ាងច្បាស់លាស់។
18 ជាថ្ងៃដែលម៉ាឡាអ៊ីកាត់បានផ្លុំសង្ខប្ញស្នែងនៅក្នុងវា។ចូរពួកអ្នកនាំគ្នាទាំងហ្វូងៗ
ទៅកាន់កន្លែងជំនុំជម្រះ។
19 ហើយមេឃនឹងត្រូវគេបើកចំហដូចជាទ្វារជាច្រើនដែលគេបានបើកចឹង។
20 ធ្វើឱ្យភ្នំប៉ើងចេញពីកន្លែងរបស់វាទៅក្នុងលំហអាកាស។វាប៉ើងដូចល្អងធូលី។
21 ពិតប្រាកដណាស់នរកជើហាន់ណាំគឺជាកន្លែងត្រៀមធ្វើទារុណកម្ម។
22 ជាទីវិលត្រលប់សម្រាប់ពួកអ្នកដែលបំពាន។
23 ពួកគេឋិតនៅក្នុងឋាននរកនេះជារៀងរហូត។
24 ពួកគេមិនដែលស្គាល់រសជាតិត្រជាក់នៅទីនោះឡើយហើយក៏គ្មានទឹកផឹកដែរ។
25 ពួកគេមិនបានផឹកទឹកឡើយលើកលែងតែទឹកក្តៅនិងទឹកខ្ទុះហូរចេញពីខ្លួនពួក
អ្នកចុះនរក។
26 ជាការតបស្នងដ៏សមហេតុផលបំផុតលើការប្រឆាំងនិងភាពវង្វេង។
27 ពិតប្រាកដណាស់នៅលោកិយពួកគេមិនដែលខ្លាចការជំនុំជំរះរបស់អល់ឡោះនៅ
ថ្ងៃបរលោកឡើយដោយសារពួកគេមិនជឿលើការបង្កើតឡើងវិញ។ប្រសិនបើពួកគេ
ខ្លាចការរស់ឡើងវិញពិតណាស់ពួកគេនឹងជឿចំពោះអល់ឡោះហើយធ្វើទង្វើកុសល។
28 ហើយពួកគេថែមទាំងបានបដិសេធនឹងអាយ៉ាត់ៗរបស់យើងដែលបានបញ្ចុះឱ្យ
អ្នកនាំសារទៀតផង។
29 ហើយអ្វីៗទាំងអស់យើងបានកត់ត្រាវាទុកនៅក្នុង សៀវភៅកំណត់ត្រា( ឡាវហុ
លម៉ះហ្វ៊ូស )រួចជាស្រេច។
30 ដូច្នេះចូរពួកអ្នកភ្លក្សចុះហើយយើងមិនបន្ថែមអ្វីឱ្យពួកអ្នកក្រៅពីទារុណកម្មឡើយ។

إِنَّ لِلْمُتَّقِينَ مَفَازًا ﴿٣١﴾ حَدَآئِقَ وَأَعْنَـٰبًا ﴿٣٢﴾ وَكَوَاعِبَ أَتْرَابًا ﴿٣٣﴾ وَكَأْسًا دِهَاقًا ﴿٣٤﴾ لَّا يَسْمَعُونَ فِيهَا لَغْوًا
وَلَا كِذَّٰبًا ﴿٣٥﴾ جَزَآءً مِّن رَّبِّكَ عَطَآءً حِسَابًا ﴿٣٦﴾ رَّبِّ ٱلسَّمَـٰوَٰتِ وَٱلْأَرْضِ وَمَا بَيْنَهُمَا ٱلرَّحْمَـٰنِ لَا يَمْلِكُونَ
مِنْهُ خِطَابًا ﴿٣٧﴾ يَوْمَ يَقُومُ ٱلرُّوحُ وَٱلْمَلَـٰٓئِكَةُ صَفًّا لَّا يَتَكَلَّمُونَ إِلَّا مَنْ أَذِنَ لَهُ ٱلرَّحْمَـٰنُ وَقَالَ
صَوَابًا ﴿٣٨﴾ ذَٰلِكَ ٱلْيَوْمُ ٱلْحَقُّ فَمَن شَآءَ ٱتَّخَذَ إِلَىٰ رَبِّهِۦ مَـَٔابًا ﴿٣٩﴾ إِنَّآ أَنذَرْنَـٰكُمْ عَذَابًا قَرِيبًا يَوْمَ
يَنظُرُ ٱلْمَرْءُ مَا قَدَّمَتْ يَدَاهُ وَيَقُولُ ٱلْكَافِرُ يَـٰلَيْتَنِى كُنتُ تُرَٰبًا ﴿٤٠﴾

31 ពិតណាស់សម្រាប់អ្នកដែលកោតខ្លាចម្ចាស់របស់ពួកគេដោយអនុវត្តតាមបទ
បញ្ជារបស់ទ្រង់និងជៀសវាងរាល់ប្រការដែលទ្រង់ហាមឃាត់នឹងទទួលបាន
ជោគជ័យតាមបំណងប្រាថ្នារបស់ពួកគេគឺឋានសួគ៌។
32 មានចំការដំណាំនិងចំការទំពាំងបាយជូរ។





33 មានស្រ្តីព្រហ្មចារីជាច្រើនដែលមានវ័យស្មើៗគ្នា។
34 ព្រមទាំងកែវដែលពេញទៅដោយស្រាទំពាំងបាយជូរ។
35 នៅក្នុងឋានសួគ៌ពួកគេមិនដែលស្តាប់ឮពាក្យសំដីឥតបានការពាក្យសំដីកុហក
និងមិនកុហកគ្នាឡើយ។
36 គឺជាការតបស្នងពីម្ចាស់របស់អ្នកដែលជាអំណោយមួយដ៏ពេញលេញ។
37 គឺមកពីម្ចាស់គ្រប់គ្រងមេឃជាច្រើនជាន់និងផែនដីនិងអ្វីៗដែលនៅរវាងវាទាំងពី
រ។នេះគឺមកពីម្ចាស់មហាសប្បុរស។ពួកគេ(មនុស្សលោក)មិនអាចនិយាយអ្វីបាន
ឡើយលុះត្រាតែមានការអនុញ្ញាតពីទ្រង់។
38 ថ្ងៃដែលជីព្រីលនិងម៉ាឡាអ៊ីកាត់ទាំងឡាយមកឈរតម្រង់ជួរ។ហើយពួកគេមិន
អាចអន្តរាគមន៍ឱ្យអ្នកណាបានទេលើកលែងតែមានការអនុញ្ញាតពីអល់ឡោះ។ហើយ
គេនិយាយនូវពាក្យសំដីណាដែលត្រឹមត្រូវប៉ុណ្ណោះ។
39 ថ្ងៃដែលគេបានរៀបរាប់ប្រាប់ពួកអ្នកនោះគឺជាថ្ងៃដែលនឹងកើតឡើងយ៉ាងពិតប្រាកដ។
ដូច្នេះអ្នកណាហើយចង់បានជោគជ័យពីទារុណកម្មរបស់អល់ឡោះនោះចូរឱ្យគេ
ជ្រើសរើសកន្លែងវិលត្រឡប់ទៅកាន់ម្ចាស់របស់គេដោយការប្រតិបត្តិនូវអំពើល្អចុះ។
40 ពិតប្រាកដណាស់យើងបានដាស់តឿនព្រមានពួកអ្នកនូវទារុណកម្មដែលនៅជិត
បំផុតនៅថ្ងៃដែលបុគ្គលម្នាក់ៗមើលទៅចំពោះអ្វីដែលដៃទាំងពីររបស់គេបានប្រព្រឹត្តនៅ
លើលោកិយកន្លងមក។ហើយអ្នកគ្មានជំនឿនឹងនិយាយដោយប្រាថ្នាចង់រួចផុតពី
ទារុណកម្មថាៈឱអនិច្ចាខ្ញុំអើយ!ធ្វើម្តេចទើបខ្ញុំក្លាយជាដីដូចជាបណ្តាសត្វវិញ។

## អាន់ណាហ្ស៊ីអាត

**គោលបំណងនៃស៊ូរ៉ោះ:** ការភ័យញ័រនៃចិត្តរបស់ពួកអ្នកបដិសេធដោយសារការបង្កើត
ឡើងវិញនិងការកាត់ក្តីតាមរយៈការបង្ហាញឱ្យឃើញពីការស្លាប់ការបង្កើតឡើងវិញ
ការប្រមូលផ្តុំនិងថ្ងៃបរលោក។

**តាហ្វសៀរ**

وَٱلنَّٰزِعَٰتِ غَرۡقٗا ١ وَٱلنَّٰشِطَٰتِ نَشۡطٗا ٢ وَٱلسَّٰبِحَٰتِ سَبۡحٗا ٣ فَٱلسَّٰبِقَٰتِ سَبۡقٗا ٤
فَٱلۡمُدَبِّرَٰتِ أَمۡرٗا ٥ يَوۡمَ تَرۡجُفُ ٱلرَّاجِفَةُ ٦ تَتۡبَعُهَا ٱلرَّادِفَةُ ٧ قُلُوبٞ يَوۡمَئِذٖ وَاجِفَةٌ ٨
أَبۡصَٰرُهَا خَٰشِعَةٞ ٩ يَقُولُونَ أَءِنَّا لَمَرۡدُودُونَ فِي ٱلۡحَافِرَةِ ١٠ أَءِذَا كُنَّا عِظَٰمٗا نَّخِرَةٗ ١١
قَالُواْ تِلۡكَ إِذٗا كَرَّةٌ خَاسِرَةٞ ١٢ فَإِنَّمَا هِيَ زَجۡرَةٞ وَٰحِدَةٞ ١٣ فَإِذَا هُم بِٱلسَّاهِرَةِ ١٤

1 អល់ឡោះបានស្បថនឹងពួកម៉ាឡាអ៊ីកាត់ដែលដកហូតវិញ្ញាណយ៉ាងឃោរឃៅ
និងខ្លាំងក្លា។
2 អល់ឡោះបានស្បថនឹងពួកម៉ាឡាអ៊ីកាត់ដែលដកយកវិញ្ញាណអ្នកមានជំនឿ
ដោយថ្នមៗនិងងាយស្រួល។
3 អល់ឡោះបានស្បថនឹងពួកម៉ាឡាអ៊ីកាត់ដែលចុះពីលើមេឃយ៉ាងលឿនតាមការ
បញ្ជារបស់អល់ឡោះ។
4 អល់ឡោះបានស្បថនឹងពួកម៉ាឡាអ៊ីកាត់ដែលដណ្តើមគ្នាទៅបំពេញកាតព្វកិច្ច
ដែលអល់ឡោះជាម្ចាស់បានបញ្ជា។
5 អល់ឡោះបានស្បថនឹងម៉ាឡាអ៊ីកាត់ដែលរៀបចំនូវបទបញ្ជារបស់អល់ឡោះដែល
ដាក់លើពួកគេ។ដូចជាម៉ាឡាអ៊ីកាត់រៀបចំខាងទង្វើរបស់មនុស្សលោក។ការស្បថនឹង
អ្វីៗទាំងនោះគឺបញ្ជាក់ពីការបង្កើតពួកគេឡើងវិញដើម្បីកាត់ក្តីនិងជំនុំជំរះ។
6 ថ្ងៃដែលគេផ្លុំត្រែលើកទីមួយធ្វើឱ្យជីវិតនៅលើលោកិយត្រូវស្លាប់ទាំងអស់។



7 ការផ្លុំត្រែលើកទីពីរកើតមានឡើងបន្ទាប់ពីលើកទីមួយហើយអ្វីៗទាំងអស់ត្រូវរស់
ឡើងវិញ។
8 នៅថ្ងៃនោះដួងចិត្តភ័យញាប់ញ័រដោយសារការមើលឃើញក្តីវន្ទត់ផ្ទាល់នឹងភ្នែក។
9 កែវភ្នែករបស់ពួកគេទម្លាក់ចុះដោយសារការភ័យខ្លាច។
10 ពួកគេនិយាយថា៖តើពួកយើងពិតជាត្រូវបានគេត្រឡប់ទៅកាន់ជីវិតដើមរបស់
ពួកយើងវិញបន្ទាប់ពីស្លាប់ឬ?
11 តើគេពិតជាត្រឡប់យើងទៅកាន់ជីវិតដើមវិញឬនៅពេលដែលពួកយើងបាន
ក្លាយជាឆ្អឹងពុកផុយហើយនោះ?
12 ពួកគេបាននិយាយទៀតថា៖ប្រសិនបើយើងត្រូវវិលត្រឡប់មែននោះវាគឺជាការ
វិលត្រឡប់ដ៏ខាតបង់បំផុត។
13 ការបង្កើតឡើងវិញវាងាយស្រួលណាស់វាគ្រាន់តែជាការផ្លុំត្រែលើកទីពីរមួយដង
ប៉ុណ្ណោះពីម៉ាឡាអ៊ីកាត់ដែលទទួលបន្ទុកខាងផ្លុំ។
14 ពេលនោះគេបំនាប្រមូលជីវិតទាំងអស់ឱ្យរស់ឡើងវិញពាសពេញផែនដីបន្ទាប់ពី
ពួកគេបានស្លាប់នៅក្នុងដី។

هَلۡ أَتَىٰكَ حَدِيثُ مُوسَىٰٓ ﴿١٥﴾ إِذۡ نَادَىٰهُ رَبُّهُۥ بِٱلۡوَادِ ٱلۡمُقَدَّسِ طُوًى ﴿١٦﴾ ٱذۡهَبۡ إِلَىٰ فِرۡعَوۡنَ إِنَّهُۥ طَغَىٰ ﴿١٧﴾
فَقُلۡ هَل لَّكَ إِلَىٰٓ أَن تَزَكَّىٰ ﴿١٨﴾ وَأَهۡدِيَكَ إِلَىٰ رَبِّكَ فَتَخۡشَىٰ ﴿١٩﴾ فَأَرَىٰهُ ٱلۡأٓيَةَ ٱلۡكُبۡرَىٰ ﴿٢٠﴾
فَكَذَّبَ وَعَصَىٰ ﴿٢١﴾ ثُمَّ أَدۡبَرَ يَسۡعَىٰ ﴿٢٢﴾ فَحَشَرَ فَنَادَىٰ ﴿٢٣﴾ فَقَالَ أَنَا۠ رَبُّكُمُ ٱلۡأَعۡلَىٰ ﴿٢٤﴾
فَأَخَذَهُ ٱللَّهُ نَكَالَ ٱلۡأٓخِرَةِ وَٱلۡأُولَىٰٓ ﴿٢٥﴾ إِنَّ فِي ذَٰلِكَ لَعِبۡرَةً لِّمَن يَخۡشَىٰٓ ﴿٢٦﴾

15 តើរឿងរបស់ណាពីមូសានិងម្ចាស់របស់គេហើយនិងសត្រូវរបស់គេហ្វៀរអ៊ូនអ្នក
(មូហាំម៉ាត់)ពិតជាបានដឹងហើយ។
16 ខណៈដែលម្ចាស់របស់គេបានហៅគាត់នៅឯជ្រលងដ៏ពិសិដ្ឋទូវ៉ា។
17 ទ្រង់បានមានបន្ទូលទៅកាន់គាត់ថា៖ចូរអ្នក(មូសា)ទៅកាន់ហ្វៀរអ៊ូនចុះពិត
ប្រាកដណាស់គេជាអ្នកបំពាននិងក្រអឺតក្រទម។
18 ចូរនិយាយទៅកាន់គេថា៖តើអ្នកចង់ជម្រះសម្អាតខ្លួនពីប្រការស៊ីរិកនិងអំពើបាប
ដែរឬទេ?
19 ហើយចង់ឱ្យខ្ញុំណែនាំអ្នកទៅកាន់ម្ចាស់របស់អ្នក (អល់ឡោះ)ដែលបង្កើតអ្នក
និងថែរក្សាអ្នករួចអ្នកនឹងកោតខ្លាចទ្រង់ហើយអ្នកនឹងប្រព្រឹត្តតែទង្វើដែលទ្រង់សព្វ
ព្រះទ័យហើយជៀសវាងពីប្រការដែលទ្រង់ខឹងសម្បាដែរឬទេ?
20 ពេលនោះមូសាបានបង្ហាញនូវមុជីហ្សាត់មួយដ៏ធំមហិមាដែលជាភស្តុតាង
បញ្ជាក់ថាគាត់ជាអ្នកនាំសាររបស់ព្រះជាម្ចាស់វាគឺដៃនិងដំបង។
21 ប៉ុន្តែហ្វៀរអ៊ូនបែរជាបដិសេធនឹងមុជីហ្សាត់នោះហើយប្រឆាំងនឹងអ្វីដែលណាពី
មូសាបានប្រើ។
22 បន្ទាប់មកគេបានបែរខ្នងប្រកែកមិនព្រមជឿនូវអ្វីដែលណាពីមូសាបាននាំមក។
23 គេបានប្រមូលកងទ័ពរបស់គេដើម្បីយកឈ្នះណាពីមូសា។ហើយគេបានស្រែក
យ៉ាងខ្លាំងថា៖
24 យើងគឺជាម្ចាស់ដ៏ខ្ពង់ខ្ពស់របស់ពួកអ្នក។ពួកអ្នកមិនអាចគោរពអ្នកផ្សេងក្រៅពី
យើងឡើយ។
25 អល់ឡោះបានដាក់ទារុណកម្មគេនៅក្នុងលោកីយ៍ដោយការលង់ទឹកសមុទ្រ
ហើយទារុណកម្មនៅថ្ងៃបរលោកគឺបញ្ចូលគេទៅក្នុងភ្លើងនរក។




26 រឿងរបស់ហ្វៀរអ៊ូនដែលទទួលទណ្ឌកម្មទាំងនៅលោកិយនិងថ្ងៃបរលោកគឺជាមេរៀនដ៏សំខាន់សម្រាប់អ្នកដែលកោតខ្លាចចំពោះអល់ឡោះ។

ج
ءَأَنتُمۡ أَشَدُّ خَلۡقًا أَمِ ٱلسَّمَآءُۚ بَنَىٰهَا ٢٧ رَفَعَ سَمۡكَهَا فَسَوَّىٰهَا ٢٨ وَأَغۡطَشَ لَيۡلَهَا وَأَخۡرَجَ ضُحَىٰهَا ٢٩
وَٱلۡأَرۡضَ بَعۡدَ ذَٰلِكَ دَحَىٰهَآ ٣٠ أَخۡرَجَ مِنۡهَا مَآءَهَا وَمَرۡعَىٰهَا ٣١ وَٱلۡجِبَالَ أَرۡسَىٰهَا ٣٢
مَتَٰعًا لَّكُمۡ وَلِأَنۡعَٰمِكُمۡ ٣٣ فَإِذَا جَآءَتِ ٱلطَّآمَّةُ ٱلۡكُبۡرَىٰ ٣٤

27 តាមការគិតរបស់ពួកអ្នក( ពួកដែលប្រឆាំងនិងបដិសេធ )តើការបង្កើតពួកអ្នកឱ្យរស់ឡើងវិញក្រោយពេលស្លាប់ពិបាកឬការបង្កើតមេឃពិបាកជាង ?
28 ទ្រង់បានលើកវាដូចជាសំណង់ដែលខ្ពស់ផុតពីផែនដីហើយទ្រង់ធ្វើឱ្យមេឃមានផ្ទៃរាបស្មើគ្មានចន្លោះប្រហោងរៀចរវេរនិងស្នាមប្រេះនោះទេ។
29 ទ្រង់បានធ្វើឱ្យផ្ទៃមេឃងងឹតក្នុងពេលយប់នៅពេលដែលព្រះអាទិត្យលិចបាត់។ ហើយទ្រង់បានធ្វើឱ្យផ្ទៃមេឃភ្លឺពេលវារះឡើងវិញ។
30 បន្ទាប់ពីបង្កើតមេឃទ្រង់បានបង្កើតផែនដីដែលមានលក្ខណៈរាប់ស្មើ។
31 ទ្រង់បានបុញ្ចេញពីដីនូវទឹកកើតជាទន្លេនិងបានបណ្តុះរុក្ខជាតិសម្រាប់សត្វពាហនៈ។
32 ហើយទ្រង់បានបង្កើតភ្នំជាស្នឹងដ៏រឹងមាំ
33 ដើម្បីជាផលប្រយោជន៍សម្រាប់ពួកអ្នកនិងសត្វពាហនៈរបស់ពួកអ្នក។ហើយអ្នកដែលបានបង្កើតអ្វីៗទាំងអស់នេះពិតជាគ្មានលទ្ធភាពក្នុងការបង្កើតវាឡើងវិញសារជាថ្មីឬ ?
34 នៅពេលដែលគេផ្លុំត្រែលើកទីពីរជាពេលដែលគ្រោះមហន្តរាយដ៏ធំបានមកដល់វាគឺថ្ងៃបរលោក។
35 ថ្ងៃនោះមនុស្សលោកនឹងនឹកឃើញនូវអ្វីដែលខ្លួនបានសាងកន្លងមក( ទង្វើល្អនិងទង្វើអាក្រក់ )។

يَوۡمَ يَتَذَكَّرُ ٱلۡإِنسَٰنُ مَا سَعَىٰ ٣٥ وَبُرِّزَتِ ٱلۡجَحِيمُ لِمَن يَرَىٰ ٣٦ فَأَمَّا مَن طَغَىٰ ٣٧ وَءَاثَرَ ٱلۡحَيَوٰةَ ٱلدُّنۡيَا ٣٨
فَإِنَّ ٱلۡجَحِيمَ هِيَ ٱلۡمَأۡوَىٰ ٣٩ وَأَمَّا مَنۡ خَافَ مَقَامَ رَبِّهِۦ وَنَهَى ٱلنَّفۡسَ عَنِ ٱلۡهَوَىٰ ٤٠ فَإِنَّ ٱلۡجَنَّةَ هِيَ
ٱلۡمَأۡوَىٰ ٤١ يَسۡـَٔلُونَكَ عَنِ ٱلسَّاعَةِ أَيَّانَ مُرۡسَىٰهَا ٤٢ فِيمَ أَنتَ مِن ذِكۡرَىٰهَآ ٤٣ إِلَىٰ رَبِّكَ
مُنتَهَىٰهَآ ٤٤ إِنَّمَآ أَنتَ مُنذِرُ مَن يَخۡشَىٰهَا ٤٥ كَأَنَّهُمۡ يَوۡمَ يَرَوۡنَهَا لَمۡ يَلۡبَثُوٓاْ إِلَّا عَشِيَّةً أَوۡ ضُحَىٰهَا ٤٦

36 ភ្លើងនរកត្រូវបានបង្ហាញឱ្យឃើញយ៉ាងច្បាស់នឹងភ្នែក។
37 អ្នកដែលបំពានដោយក្បួរធ្វើអំពើអាក្រក់និងអំពើបាប។
38 ហើយពួកគេស្រលាញ់ជីវិតលោកិយខ្លាំងជាងជីវិតបរលោក។
39 ពិតប្រាកដណាស់នរកជើហ៊ីមគឺជាទីលំនៅរបស់ពួកគេ។
40 41 រីឯអ្នកដែលប្រុងប្រយ័ត្នចំពោះការឈរនៅមុខព្រះជាម្ចាស់របស់គេនៅថ្ងៃបរលោក។ហើយពួកគេបានទប់ស្កាត់ខ្លួនរបស់ពួកគេមិនឱ្យប្រព្រឹត្តប្រការដែលទ្រង់បានហាមឃាត់។ពិតណាស់ឋានសួគ៌គឺជាទីលំនៅរបស់ពួកគេ។
42 ពួកដែលបដិសេធនឹងការបង្កើតឡើងវិញសួរអ្នក( មូ៉ហាំម៉ាត់ )ថាតើថ្ងៃបរលោកនឹងកើតឡើងនៅពេលណា ?
43 អ្នកមិនមែនជាអ្នកដឹងអំពីពេលវេលារបស់វាឡើយ។ហើយវាក៏មិនមែនជាកិច្ចការរបស់អ្នកដែរ។តាមពិតកិច្ចការរបស់អ្នកគឺត្រូវត្រៀមខ្លួនសម្រាប់វា។
44 ទីបញ្ចប់របស់វាគឺមានតែម្ចាស់របស់អ្នកទេដែលដឹង។



45 តាមពិតអ្នកគ្រាន់តែជាអ្នកដាស់តឿនព្រមានចំពោះអ្នកណាដែលខ្លាចថ្ងៃ
បរលោកប៉ុណ្ណោះ។ព្រោះវានឹងទទួលបានផលពីការដាស់តឿនព្រមានរបស់អ្នក។
46 ថ្ងៃដែលពួកគេមើលឃើញថាការរស់នៅក្នុងលោកីយនេះគ្មានអ្វីក្រៅពីរយៈពេល
តែមួយល្ងាចឬមួយព្រឹកប៉ុណ្ណោះ។

## អាហ្ពាសា

**គោលបំណងនៃស៊ូរ៉ោះ:** ជាតុពិតនៃការអំពាវនាវរបស់គម្ពីគួរអានភាពថ្លៃថ្នូរមានសម្រាប់អ្នកទទួលផលពីវាហើយសេចក្តីទាប់ថោកមានសម្រាប់អ្នកដែលងាក់ចេញពីវា។

**តាហ្វសៀរ**

عَبَسَ وَتَوَلَّىٰٓ ١ أَن جَآءَهُ ٱلْأَعْمَىٰ ٢ وَمَا يُدْرِيكَ لَعَلَّهُۥ يَزَّكَّىٰٓ ٣ أَوْ يَذَّكَّرُ فَتَنفَعَهُ ٱلذِّكْرَىٰٓ ٤
أَمَّا مَنِ ٱسْتَغْنَىٰ ٥ فَأَنتَ لَهُۥ تَصَدَّىٰ ٦ وَمَا عَلَيْكَ أَلَّا يَزَّكَّىٰ ٧ وَأَمَّا مَن جَآءَكَ يَسْعَىٰ ٨
وَهُوَ يَخْشَىٰ ٩ فَأَنتَ عَنْهُ تَلَهَّىٰ ١٠ كَلَّآ إِنَّهَا تَذْكِرَةٌ ١١ فَمَن شَآءَ ذَكَرَهُۥ ١٢
فِى صُحُفٍ مُّكَرَّمَةٍ ١٣ مَّرْفُوعَةٍ مُّطَهَّرَةٍۭ ١٤ بِأَيْدِى سَفَرَةٍ ١٥ كِرَامٍۭ بَرَرَةٍ ١٦

1 ណាពីបានធ្វើមុខក្រញូវនិងងាកមុខចេញ។
2 ពីព្រោះមានជនពិការភ្នែកម្នាក់មកជួបគាត់គេឈ្មោះអាប់ឌុលឡោះពិនអ៊ុម្មឹកទូ
មមកសុំការណែនាំពីគាត់ក្នុងខណៈនោះណាពីកំពុងតែរវល់នៅជាមួយពួកមេដឹកនាំ
មានមុខមាត់នៃពួកគូរេស្សមួយក្រុមដោយសង្ឃឹមថាពួកគេទាំងនោះនឹងទទួលបាន
ការចង្អុលបង្ហាញ។
3 តើអ្នក(មូហាំម៉ាត់)អាចដឹងយ៉ាងដូម្តេចបាន?ជួនកាលជនពិការនេះអាចមក
សំអាតខ្លួនរបស់គេពីបាបកម្ម។
4 ឬក៏គេចង់បានការទូន្មានអំពីការទូន្មានរបស់អ្នកហើយវាអាចផ្តល់ផលប្រយោជន៍
ដល់គេ ។
5 រីឯអ្នកដែលមានទ្រព្យសម្បត្តិគ្រប់គ្រាន់គេមិនត្រូវការសេចក្តីជំនឿដែលអ្នកនាំ
មកនោះទេ។
6 អ្នកសំដៅទៅរកគេទាំងខ្លួនប្រាណនិងសំដីហើយគេមិនត្រូវការអ្នកនិងងាក់ចេញ
ពីអ្វីដែលអ្នកនាំមក។
7 អ្នកគ្មានបញ្ហាអ្វីនោះទេប្រសិនបើគេមិនព្រមចូលឥស្លាមនិងមិនបានទទួលការ
ចង្អុលបង្ហាញនោះ។
8 រីឯអ្នកដែលខំព្យាយាមមកជួបអ្នកដោយប្រញាប់ប្រញាល់ដើម្បីសុំការបង្ហាញផ្លូវ
ពីអ្នកទៅកាន់អំពើល្អ។
9 ហើយគេកោតខ្លាចម្ចាស់របស់គេ។
10 អ្នកបែរជាព្រងើយកន្តើយចំពោះគេដោយសារពួកមានមុខមាត់គូរេស្សទៅវិញ។
11 វាមិនដូច្នោះទេ!ពិតណាស់ការទូន្មានក្នុងនេះរំលឹកគឺសម្រាប់អ្នកព្រមទទួលវា។
12 ដូច្នេះអ្នកណាហើយមានបំណងនឹករលឹកចំពោះអល់ឡោះគេនឹងនឹករលឹក
ចំពោះទ្រង់ហើយគេពិតជានឹងយកគម្ពីរគួរអានធ្វើជាមេរៀន។
13 គម្ពីគួរអាននេះគឺជាការដាស់រំឭកដែលមានចែងនៅក្នុងគម្ពីរដែលត្រូវបានគេ
លើកតម្កើង។
14 ប្រកបដោយភាពខ្ពង់ខ្ពស់ព្រមទាំងជ្រះស្អាតនឹងមិនអនុញ្ញាតឱ្យប៉ះពាល់វាទេនូវ
អ្វីដែលកខ្វក់។
15 វានៅនឹងដៃអ្នកដែលនាំវាហ៊ីមកគឺម៉ាឡៃអ៊ីកាត់។

16 ដែលថ្កុំថ្កើងនៅចំពោះម្ចាស់របស់គេ។ហើយនិងជាអ្នកដែលប្រព្រឹត្តតែអំពើល្អ
និងប្រតិបត្តិយ៉ាងខ្ជាប់ខ្ជួន។

قُتِلَ ٱلۡإِنسَٰنُ مَآ أَكۡفَرَهُۥ ١٧ مِنۡ أَيِّ شَيۡءٍ خَلَقَهُۥ ١٨ مِن نُّطۡفَةٍ خَلَقَهُۥ فَقَدَّرَهُۥ ١٩
ثُمَّ ٱلسَّبِيلَ يَسَّرَهُۥ ٢٠ ثُمَّ أَمَاتَهُۥ فَأَقۡبَرَهُۥ ٢١ ثُمَّ إِذَا شَآءَ أَنشَرَهُۥ ٢٢ كَلَّا لَمَّا يَقۡضِ مَآ أَمَرَهُۥ ٢٣
فَلۡيَنظُرِ ٱلۡإِنسَٰنُ إِلَىٰ طَعَامِهِۦٓ ٢٤ أَنَّا صَبَبۡنَا ٱلۡمَآءَ صَبّٗا ٢٥ ثُمَّ شَقَقۡنَا ٱلۡأَرۡضَ شَقّٗا ٢٦ فَأَنۢبَتۡنَا فِيهَا حَبّٗا ٢٧
وَعِنَبٗا وَقَضۡبٗا ٢٨ وَزَيۡتُونٗا وَنَخۡلٗا ٢٩ وَحَدَآئِقَ غُلۡبٗا ٣٠ وَفَٰكِهَةٗ وَأَبّٗا ٣١ مَّتَٰعٗا لَّكُمۡ وَلِأَنۡعَٰمِكُمۡ ٣٢

17 មនុស្សលោកដែលប្រឆាំងត្រូវបានគេដាក់បណ្តាសារនូវអ្វីដែលពួកគេបាន
ប្រឆាំងយ៉ាងខ្លាំងក្លាចំពោះអល់ឡោះ។
18 តើអល់ឡោះបានបង្កើតពួកគេពីអ្វី ?ហេតុអ្វីបានជាពួកគេប្រអើតក្រទាមនិង
ប្រឆាំងនៅលើផែនដីបែបនេះ ?
19 បង្កើតពីទឹកដែលទន់ខ្សោយហើយគេក៏បានកំណត់ឱ្យគេរួចជាស្រេចនូវជីវិតរស់
នៅពីមួយដំណាក់កាលទៅមួយដំណាក់កាល។
20 បន្ទាប់មកទ្រង់បានសម្រួលផ្លូវដល់គេបន្ទាប់ពីគេបានកើតចេញពីផ្ទៃរបស់ម្តាយគេ។
21 បន្ទាប់គេបានកំណត់អាយុរបស់គេហើយក៏បានឱ្យគេស្លាប់ហើយនឹងបានផ្តល់ឱ្យ
គេនូវផ្នូរសម្រាប់ស្នាក់នៅរហូតដល់ថ្ងៃគេបង្កើតឡើងវិញ។
22 បន្ទាប់មកទ្រង់ធ្វើឱ្យគេរស់ឡើងវិញនៅពេលណាដែលទ្រង់ចង់ដើម្បីកាត់ក្តីនិង
ជំនុំជំរះ។
23 មិនដូចអ្វីដែលពួកគេអះអាងឡើយដែលថាគេបានបំពេញកិច្ចការយ៉ាងពិត
ប្រាកដទៅចំពោះម្ចាស់របស់ពួកគេតាមពិតពួកគេមិនបានបំពេញនូវអ្វីដែលអល់
ឡោះបានដក់លើពួកគេឡើយ។
24 ដូច្នេះចូរឱ្យមនុស្សលោកដែលប្រឆាំងនឹងអល់ឡោះមើលទៅកាន់ចំណីអាហារ
របស់គេដែលគេហូបចុះតើទទួលបានពីណា ?
25 ជាតុពិតរបស់វាគឺមកពីទឹកភ្លៀងដែលបញ្ចុះពីលើមេឃមកយ៉ាងច្រើនសន្ធឹកសន្ធាប់។
26 បន្ទាប់មកយើងបានបំបែកដីជាបំណែកៗហើយរុក្ខជាតិក៏ដុះចេញមក។
27 ហើយរុក្ខជាតិនោះលូតលាស់រហូតដល់ចេញផ្លែផ្កាដូចជាស្រូវសាលីពោតនិងផ្សេ
ងៗទៀត។
28 ហើយបានបណ្តុះដើមទំពាំងបាយជូរនិងបន្លែស្រស់ដើម្បីជាចំណីសត្វរបស់ពួកគេ។
29 ហើយនិងដើមអូលីវនិងដើមល្មើ។
30 ហើយនិងសួនឧទ្យានដែលមានដើមឈើធំៗជាច្រើន។
31 និងផលានុផលហើយនិងរុក្ខជាតិសម្រាប់សត្វពាហនៈ។
32 ជាផលប្រយោជន៍សម្រាប់ពួកអ្នកនិងសត្វពាហនៈរបស់ពួកអ្នក។

فَإِذَا جَآءَتِ ٱلصَّآخَّةُ ٣٣ يَوۡمَ يَفِرُّ ٱلۡمَرۡءُ مِنۡ أَخِيهِ ٣٤ وَأُمِّهِۦ وَأَبِيهِ ٣٥ وَصَٰحِبَتِهِۦ وَبَنِيهِ ٣٦
لِكُلِّ ٱمۡرِيٕٖ مِّنۡهُمۡ يَوۡمَئِذٖ شَأۡنٞ يُغۡنِيهِ ٣٧ وُجُوهٞ يَوۡمَئِذٖ مُّسۡفِرَةٞ ٣٨ ضَاحِكَةٞ مُّسۡتَبۡشِرَةٞ
٣٩ وَوُجُوهٞ يَوۡمَئِذٍ عَلَيۡهَا غَبَرَةٞ ٤٠ تَرۡهَقُهَا قَتَرَةٌ ٤١ أُوْلَٰٓئِكَ هُمُ ٱلۡكَفَرَةُ ٱلۡفَجَرَةُ ٤٢

33 ហើយនៅពេលដែលសម្រែកយ៉ាងខ្លាំងនៃការផ្លុំត្រែដែលធ្វើឱ្យត្រចៀកស្តាប់
លែងឮបានមកដល់វាគឺជាការផ្លុំត្រែលើកទីពីរ។
34 ជាថ្ងៃដែលគេរត់គេចពីបងប្អូនរបស់គេ។
35 រត់គេចពីម្តាយនិងឪពុករបស់ពួកគេ។



36 និងរត់គេចពីភរិយានិងកូនចៅរបស់គេ។
37 នៅថ្ងៃនោះបុគ្គលម្នាក់ៗមិនខ្វល់ពីសាច់ញាតិរបស់ខ្លួនឡើយដោយសារស្ថាន
ភាពគួរឱ្យរន្ធត់នៅក្នុងថ្ងៃនោះ។
38 ទឹកមុខ(អ្នកមានជំនឿ)នៅថ្ងៃនោះរីករាយ ស្រស់ស្រាយ។
39 សើចសប្បាយរីករាយនូវអ្វីដែលអល់ឡោះបានត្រៀមសម្រាប់ពួកគេពីការស
ណ្ដោះប្រណីរបស់ទ្រង់។
40 ហើយទឹកមុខ(របស់អ្នកគ្មានជំនឿ)នៅថ្ងៃនោះគឺប្រឡាក់សុទ្ធតែធូលី។
41 ភាពខ្មៅងងឹតបានគ្របដណ្ដប់លើផ្ទៃមុខ។
42 ពួកដែលមានលក្ខណៈសម្បត្តិបែបនោះគឺជាពួកដែលប្រឆាំងនិងល្មើសបំពាន។

## អាត់តឹកវៀរ

**គោលបំណងនៃស៊ូរ៉ោះ**

រូបភាពនៃថ្ងៃបរលោកគឺការបំបែកចក្រវាលបន្ទាប់ពីដល់ពេលកំណត់របស់វា។

**តាហ្សៀរ**

إِذَا ٱلشَّمۡسُ كُوِّرَتۡ ١ وَإِذَا ٱلنُّجُومُ ٱنكَدَرَتۡ ٢ وَإِذَا ٱلۡجِبَالُ سُيِّرَتۡ ٣ وَإِذَا ٱلۡعِشَارُ عُطِّلَتۡ
٤ وَإِذَا ٱلۡوُحُوشُ حُشِرَتۡ ٥ وَإِذَا ٱلۡبِحَارُ سُجِّرَتۡ ٦ وَإِذَا ٱلنُّفُوسُ زُوِّجَتۡ ٧
وَإِذَا ٱلۡمَوۡءُۥدَةُ سُئِلَتۡ ٨ بِأَيِّ ذَنۢبٖ قُتِلَتۡ ٩ وَإِذَا ٱلصُّحُفُ نُشِرَتۡ ١٠ وَإِذَا ٱلسَّمَآءُ كُشِطَتۡ ١١
وَإِذَا ٱلۡجَحِيمُ سُعِّرَتۡ ١٢ وَإِذَا ٱلۡجَنَّةُ أُزۡلِفَتۡ ١٣ عَلِمَتۡ نَفۡسٞ مَّآ أَحۡضَرَتۡ ١٤

1 នៅពេលដែលព្រះអាទិត្យត្រូវបានបត់បញ្ចូលគ្នា ហើយបាត់បង់រស្មីរបស់វា។
2 នៅពេលដែលផ្កាយទាំងឡាយធ្លាក់បែកខ្ចាត់ខ្ចាយ ហើយបាត់បង់ពន្លឺ។
3 នៅពេលដែលភ្នំទាំងឡាយបើងខ្ទេចខ្ទីចេញពីកន្លែងរបស់វា។
4 នៅពេលដែលមេអូដ្ឋមានផ្ទៃពោះដែលរបស់មានតម្លៃត្រូវបានគេបោះបង់ចោល។
5 នៅពេលដែលសត្វសាហាវត្រូវបានគេប្រមូលផ្ដុំជាមួយមនុស្សលោកក្នុងពេលតែ
មួយ។
6 នៅពេលសមុទ្រទាំងឡាយត្រូវបានគេដុតឱ្យឆេះក្លាយជាភ្លើង។
7 នៅពេលដែលគេផ្សំផ្គុំជីវិតឱ្យសាកសមទៅនឹងវាអ្នកបំពានគូរជាមួយអ្នកបំពាន
ហើយអ្នកកោតខ្លាចគូរជាមួយអ្នកកោតខ្លាច។
8 នៅពេលទារិកាដែលគេបានកប់ទាំងរស់ត្រូវបានអល់ឡោះសួរ។
9 ដោយសារបាបកម្មអ្វីបានជានាងត្រូវបានគេសម្លាប់បែបនេះ?
10 នៅពេលដែលបញ្ជីកត់ត្រាទង្វើរបស់មនុស្សត្រូវបានផ្សព្វផ្សាយដើម្បីឱ្យពួកគេម្នា
ក់ៗអាននូវទង្វើរបស់ពួកគេដែលបានសាង។
11 និងនៅពេលដែលមេឃត្រូវបានគេបកចេញពីកន្លែងរបស់វាដូចជាគេបកស្បែក
ចេញពីសត្វពពែ។
12 នៅពេលដែលភ្លើងនរកត្រូវបានបញ្ឆេះ។
13 នៅពេលឋានសួគ៌គេបាននាំមកជិតពួកអ្នកដែលកោតខ្លាច។
14 នៅក្នុងថ្ងៃនោះបុគ្គលគ្រប់រូបដឹងនូវអ្វីដែលខ្លួនបានប្រព្រឹត្តកន្លងមក។

فَلَآ أُقۡسِمُ بِٱلۡخُنَّسِ ١٥ ٱلۡجَوَارِ ٱلۡكُنَّسِ ١٦ وَٱلَّيۡلِ إِذَا عَسۡعَسَ ١٧ وَٱلصُّبۡحِ إِذَا تَنَفَّسَ ١٨
إِنَّهُۥ لَقَوۡلُ رَسُولٖ كَرِيمٖ ١٩ ذِي قُوَّةٍ عِندَ ذِي ٱلۡعَرۡشِ مَكِينٖ ٢٠ مُّطَاعٖ ثَمَّ أَمِينٖ ٢١





وَمَا صَاحِبُكُم بِمَجْنُونٍ ﴿٢٢﴾ وَلَقَدْ رَءَاهُ بِٱلْأُفُقِ ٱلْمُبِينِ ﴿٢٣﴾ وَمَا هُوَ عَلَى ٱلْغَيْبِ بِضَنِينٍ ﴿٢٤﴾
وَمَا هُوَ بِقَوْلِ شَيْطَٰنٍ رَّجِيمٍ ﴿٢٥﴾ فَأَيْنَ تَذْهَبُونَ ﴿٢٦﴾ إِنْ هُوَ إِلَّا ذِكْرٌ لِّلْعَٰلَمِينَ ﴿٢٧﴾
لِمَن شَآءَ مِنكُمْ أَن يَسْتَقِيمَ ﴿٢٨﴾ وَمَا تَشَآءُونَ إِلَّآ أَن يَشَآءَ ٱللَّهُ رَبُّ ٱلْعَٰلَمِينَ ﴿٢٩﴾

15 អល់ឡោះបានស្បថនឹងហ្វូងផ្កាយដែលបាត់ពន្លឺមុនពេលដែលវាលេចឡើងនៅពេលរាត្រី។
16 និងហ្វូងផ្កាយដែលដើរតាមគន្លងរបស់វារួចក៏លិចបាត់នៅពេលព្រឹកប្រៀបដូចជាសត្វប្រើសរត់ចូលក្នុងជំរករបស់វា។
17 ហើយអល់ឡោះបានស្បថនឹងពេលយប់នៅពេលដែលវាចាប់ផ្ដើមមកដល់និងទីបញ្ចប់របស់វា។
18 ហើយអល់ឡោះបានស្បថនឹងពេលព្រលឹមក្នុងពេលដែលវាបញ្ចេញពន្លឺ។
19 ពិតណាស់គម្ពីរគួរអានដែលបានបញ្ចុះមកឱ្យណាពីមូហាំម៉ាត់គឺជាបន្ទូលរបស់អល់ឡោះដែលបានផ្ដល់ឱ្យម៉ាឡាអ៊ីកាត់ជីព្រីលនាំមកឱ្យរ៉សូលុលឡោះ។
20 ជាអ្នកមានអានុភាពខ្លាំងក្លានឹងឋានៈខ្ពង់ខ្ពស់ចំពោះអល់ឡោះ។
21 ជាអ្នកដែលក្រុមនៅលើមេឃគោរពនិងជាអ្នកស្មោះត្រង់ក្នុងការផ្ដល់វ៉ាហ៊ី។
22 ហើយមិត្តរបស់ពួកអ្នកមូហាំម៉ាត់ដែលនៅជាមួយពួកអ្នកហើយពួកអ្នកបានដឹងពីវិចារណញ្ញាណរបស់គាត់ភាពស្មោះត្រង់របស់គាត់ហើយគាត់មិនមែនជាមនុស្សវិកលចរិតដូចពួកអ្នកចោទឡើយ។
23 ហើយជាការពិតណាស់មិត្តរបស់អ្នកបានឃើញគេ ជីព្រីលលើរូបភាពដែលគេបង្កើតគាត់យ៉ាងច្បាស់នៅឯជើងមេឃ។
24 ហើយមិត្តរបស់អ្នកមិនកំណាញ់លើពួកអ្នកក្នុងការផ្សព្វផ្សាយនូវបទបញ្ញាដែលដាក់មកលើពួកអ្នក (សាររបស់អល់ឡោះ)ឡើយ។ហើយថែមទាំងមិនយកកំរៃដូចពពួកគ្រូទាយទៀត។
25 គម្ពីរគួរអានមិនមែនជាសម្ដីរបស់ស្ហៃតនលួចស្ដាប់ ពីលើមេឃដែលត្រូវគេដេញប្រហារឡើយ។
26 តើផ្លូវមួយណាដែលពួកអ្នកនឹងជ្រើសរើសវាដើម្បីបដិសេធថាវាមិនមែនមកពីអល់ឡោះបន្ទាប់មានភស្តុតាងទាំងនេះ?
27 គម្ពីរគួរអានគ្មានអ្វីក្រៅពីការទូន្មាននិងជាស់រំឭកដល់ជិននិងមនុស្សឡើយ។
28 សម្រាប់អ្នកណាដែលមានបំណងចង់ស្ថិតលើមាគ៌ាដ៏ត្រឹមត្រូវក្នុងចំណោមពួកអ្នក។
29 ហើយក្ដីប្រាថ្នាចង់បានភាពខ្ជាប់ខ្ជួនត្រឹមត្រូវរបស់ពួកអ្នកនឹងមិនទាន់សម្រេចទេលើកលែងតែអល់ឡោះទ្រង់សព្វព្រះទ័យហើយទ្រង់ជាម្ចាស់ពិភពលោកទាំងមូល។

## អាល់អ៊ីមហ្វីតរ

**គោលបំណងនៃស៊ូរ៉ោះ:** រូបភាពនៃថ្ងៃបរលោកគឺការបែកខ្ចាត់ខ្ចាយនៃម៉ោខលោកពីសភាពធម្មតានិងការផ្លាស់ប្ដូរស្ថានភាពនិងដំណើររបស់ពួកគេ។

**តាហ្សៀរ**

إِذَا ٱلسَّمَآءُ ٱنفَطَرَتْ ﴿١﴾ وَإِذَا ٱلْكَوَاكِبُ ٱنتَثَرَتْ ﴿٢﴾ وَإِذَا ٱلْبِحَارُ فُجِّرَتْ ﴿٣﴾ وَإِذَا ٱلْقُبُورُ بُعْثِرَتْ ﴿٤﴾
عَلِمَتْ نَفْسٌ مَّا قَدَّمَتْ وَأَخَّرَتْ ﴿٥﴾ يَٰٓأَيُّهَا ٱلْإِنسَٰنُ مَا غَرَّكَ بِرَبِّكَ ٱلْكَرِيمِ ﴿٦﴾
ٱلَّذِى خَلَقَكَ فَسَوَّىٰكَ فَعَدَلَكَ ﴿٧﴾ فِىٓ أَىِّ صُورَةٍ مَّا شَآءَ رَكَّبَكَ ﴿٨﴾ كَلَّا بَلْ تُكَذِّبُونَ بِٱلدِّينِ ﴿٩﴾





وَإِنَّ عَلَيْكُمْ لَحَٰفِظِينَ ١٠ كِرَامًا كَٰتِبِينَ ١١ يَعْلَمُونَ مَا تَفْعَلُونَ ١٢

1 នៅពេលដែលមេឃប្រេះបែកដោយសារការចុះមកក្រោមរបស់ពួកម៉ាឡាអ៊ីកាត់។

2 ភពផ្កាយទាំងឡាយធ្លាក់បែកខ្ចេចខ្ចី។

3 នៅពេលដែលសមុទ្រទាំងឡាយផ្ទុះឡើងព្រមគ្នាក្លាយជាសមុទ្រតែមួយ។

4 នៅពេលដែលដីនៅផ្នូរទាំងឡាយត្រូវក្រឡាប់ហើយសាកសពទាំងអស់ត្រូវគាស់ចេញមកក្រៅ។

5 នៅពេលនោះជីវិតនីមួយៗដឹងពីទង្វើដែលខ្លួនបានធ្វើល្អឬអាក្រក់និងអ្វីដែលខ្លួនបានពន្យារមិនទាន់ធ្វើល្អឬអាក្រក់។

6 នែមនុស្សលោកដែលប្រឆាំងនឹងម្ចាស់របស់អ្នកតើមានអ្វីបោកបញ្ឆោតអ្នកនិងបោកប្រាស់អ្នក ទើបធ្វើឱ្យអ្នកហ៊ានប្រឆាំងនឹងម្ចាស់របស់អ្នកដោយទ្រង់បានអត់ឱនមិនប្រញាប់ធ្វើទារុណកម្មលើពួកអ្នក?

7 ទ្រង់បានបង្កើតអ្នកពីគ្មានរូបរាងហើយធ្វើឱ្យអ្នកមានកាយសម្បទាសមរម្យនិងអវយវៈសមនឹងដងខ្លួន។

8 ក្នុងរូបរាងណាមួយដែលទ្រង់សព្វព្រះទ័យទ្រង់នឹងបង្កើតអ្នកតាមនោះ។ពិតណាស់វាជាលាភសក្ការៈដ៏ធំធេងបំផុតដែលទ្រង់មិនបង្កើតអ្នកឱ្យមានមានរូបរាងដូចសត្វលាសត្វស្វាសត្វឆ្កែឬអ្វីផ្សេងពីនោះ។

9 មិនដូចអ្វីដែលពួកអ្នកគិតឡើយ!ប៉ុន្តែពួកអ្នកបដិសេធចំពោះការតបស្នងនៅថ្ងៃបរលោក។

10 ហើយពិតប្រាកដណាស់ពួកអ្នកគឺមានម៉ាឡាអ៊ីកាត់ជាអ្នកតាមឃ្លាំមើលទង្វើរបស់ពួកអ្នក។

11 ជាអ្នកថ្កុំថ្កើងចំពោះអល់ឡោះនិងជាអ្នកកត់ត្រារាល់ទង្វើពួករបស់អ្នក។

12 ពួកគេដឹងនូវអ្វីដែលពួកអ្នកប្រព្រឹត្តហើយពួកគេបានកត់ត្រាទុក។

إِنَّ ٱلْأَبْرَارَ لَفِى نَعِيمٍ ١٣ وَإِنَّ ٱلْفُجَّارَ لَفِى جَحِيمٍ ١٤ يَصْلَوْنَهَا يَوْمَ ٱلدِّينِ ١٥
وَمَا هُمْ عَنْهَا بِغَآئِبِينَ ١٦ وَمَآ أَدْرَىٰكَ مَا يَوْمُ ٱلدِّينِ ١٧ ثُمَّ مَآ أَدْرَىٰكَ مَا يَوْمُ ٱلدِّينِ ١٨
يَوْمَ لَا تَمْلِكُ نَفْسٌ لِّنَفْسٍ شَيْـًٔا ۖ وَٱلْأَمْرُ يَوْمَئِذٍ لِّلَّهِ ١٩

13 ពិតប្រាកដណាស់បណ្ដាអ្នកដែលបានសាងអំពើល្អនិងគោរពតាមបទបញ្ជារគឺស្ថិតក្នុងឋានសួគ៌ណាអ៊ីមនៅថ្ងៃបរលោក។

14 ហើយពិតប្រាកដណាស់ពួកដែលប្រព្រឹត្តអំពើអាក្រក់និងបំពានគឺស្ថិតក្នុងភ្លើងនរកដែលឆេះសន្ធោសន្ធៅ។

15 ពួកគេចុះនរកនៅថ្ងៃតបស្នងដែលពួកអ្នកធ្លាប់បានបដិសេធហើយភ្លក់រសជាតិកម្តៅរបស់វា។

16 ពួកគេមិនអាចឃ្លាតចេញពីវាជាដាច់ខាត។ពួកគេនឹងស្ថិតនៅក្នុងនរកនេះជារៀងរហូត។

17 តើអ្វីដែលធ្វើឱ្យអ្នកដឹងថាថ្ងៃជំនុំជំរះជាអ្វីនោះ?

18 បន្ទាប់មកតើអ្វីដែលធ្វើឱ្យអ្នកដឹងថាថ្ងៃជំនុំជំរះជាអ្វីនោះ?

19 នៅថ្ងៃនោះគ្មាននរណាម្នាក់អាចជួយដល់ម្នាក់ទៀតបានជាដាច់ខាត។កិច្ចការទាំងអស់ក្នុងថ្ងៃនោះគឺនៅលើអល់ឡោះតែម្នាក់គត់ទ្រង់ជាអ្នកសម្រេចកិច្ចការទៅតាមការសព្វព្រះទ័យរបស់ទ្រង់គ្មាននរណាម្នាក់ក្រៅពីទ្រង់ឡើយ។





# អាល់មូតហ្វហ្វីហ្វីន

**គោលបំណងនៃស៊ូរ៉ោះ** ការផ្តោតលើស្ថានភាពមនុស្សក្នុងពេលថ្លឹងទំនិញលក់ដូរនិងស្ថានភាពក្នុងថ្ងៃបរលោកដើម្បីគម្រាមដល់អ្នកបន្លំភ្នែកជញ្ជីងនិងអ្នកកុហកហើយផ្តល់ក្តីមេត្តាដល់អ្នកមានជំនឿនិងអ្នកទន់ខ្សោយ។

**តាហ្វសៀរ**

وَيۡلٞ لِّلۡمُطَفِّفِينَ ١ ٱلَّذِينَ إِذَا ٱكۡتَالُواْ عَلَى ٱلنَّاسِ يَسۡتَوۡفُونَ ٢ وَإِذَا كَالُوهُمۡ أَو وَّزَنُوهُمۡ يُخۡسِرُونَ ٣
أَلَا يَظُنُّ أُوْلَٰٓئِكَ أَنَّهُم مَّبۡعُوثُونَ ٤ لِيَوۡمٍ عَظِيمٖ ٥ يَوۡمَ يَقُومُ ٱلنَّاسُ لِرَبِّ ٱلۡعَٰلَمِينَ ٦

1 ភាពវិនាសអន្តរាយគឺសម្រាប់ពួកដែលតែបន្លំភ្នែកជញ្ជីង។
2 ជាពួកអ្នកដែលទាមទារចង់បានការវាល់គ្រប់ចំនួននៅពេលទិញពីអ្នកដទៃ។
3 ហើយនៅពេលវាល់ឬថ្លឹងឱ្យអ្នកដទៃវិញគឺពួកគេវាល់ឬថ្លឹងឱ្យខ្វះមិនគ្រប់ឡើយ។ហើយនោះជាស្ថានភាពអ្នករស់នៅម៉ាឌីណាះនៅពេលដែលណាពីបានភៀសខ្លួនទៅរកពួកគេ។
6 តើពួកគេមិនគិតថាពួកគេនឹងត្រូវរស់ឡើងវិញហើយត្រូវគេសួរពីអ្វីដែលពួកគេបានធ្វើទេឬ ?
5 ដើម្បីជំនុំជំរះនិងតបស្នងនៅថ្ងៃមួយដ៏ធំធេងគឺថ្ងៃបរលោកជាពេលដែលវេទនានិងភ័យរន្ធត់បំផុត។
4 គឺនៅថ្ងៃដែលមនុស្សលោកនឹងឈរនៅចំពោះមុខម្ចាស់គ្រប់គ្រងពិភពទាំងអស់ដើម្បីកាត់ក្តី។

كَلَّآ إِنَّ كِتَٰبَ ٱلۡفُجَّارِ لَفِي سِجِّينٖ ٧ وَمَآ أَدۡرَىٰكَ مَا سِجِّينٞ ٨ كِتَٰبٞ مَّرۡقُومٞ ٩ وَيۡلٞ يَوۡمَئِذٖ
لِّلۡمُكَذِّبِينَ ١٠ ٱلَّذِينَ يُكَذِّبُونَ بِيَوۡمِ ٱلدِّينِ ١١ وَمَا يُكَذِّبُ بِهِۦٓ إِلَّا كُلُّ مُعۡتَدٍ أَثِيمٍ ١٢ إِذَا تُتۡلَىٰ عَلَيۡهِ
ءَايَٰتُنَا قَالَ أَسَٰطِيرُ ٱلۡأَوَّلِينَ ١٣ كَلَّاۖ بَلۡۜ رَانَ عَلَىٰ قُلُوبِهِم مَّا كَانُواْ يَكۡسِبُونَ ١٤ كَلَّآ إِنَّهُمۡ عَن رَّبِّهِمۡ
يَوۡمَئِذٖ لَّمَحۡجُوبُونَ ١٥ ثُمَّ إِنَّهُمۡ لَصَالُواْ ٱلۡجَحِيمِ ١٦ ثُمَّ يُقَالُ هَٰذَا ٱلَّذِي كُنتُم بِهِۦ تُكَذِّبُونَ ١٧

7 មិនដូចអ្វីដែលពួកអ្នកគិតឡើយ !ដែលថាគ្មានការធ្វើឱ្យរស់ឡើងវិញនោះ។ការពិតបញ្ជីរបស់ពួកប្រព្រឹត្តអំពើអាក្រក់គឺស្ថិតក្នុងស៊ិជ្ជីន។
8 តើអ្វីដែលធ្វើឱ្យអ្នកដឹងថាស៊ិជ្ជីនជាអ្វីនោះ ?
9 គឺជាបញ្ជីមួយដែលត្រូវបានគេកត់ត្រាទុកដោយគ្មានការកែប្រែគ្មានការបន្ថែមនិងបន្ថយឡើយ។
10 ភាពវិនាសអន្តរាយនៅថ្ងៃនោះគឺសម្រាប់ពួកដែលបដិសេធ។
11 គឺជាពួកដែលបដិសេធនឹងថ្ងៃជំនុំជំរះដោយគិតថាអល់ឡោះនឹងមិនកាត់ក្តីនូវវេទម្ងើដែលបានសាងនៅលើលោកិយ៍។
12 គ្មានអ្នកណាបដិសេធនឹងថ្ងៃនោះឡើយលើកលែងតែអ្នកដែលប្រព្រឹត្តអំពើឧក្រិដ្ឋល្មើសហួសហេតុ ងប់ងុលក្នុងផ្លូវបាបកម្មនេះ។
13 នៅពេលណាគេសូត្រអាយ៉ាត់ៗដែលគេបញ្ចុះមកឱ្យណាពីមូហាំម៉ាត់គេនិយាយថា៖នេះជារឿងព្រេងនិទានដែលគេចងក្រងពីអ្នកសម័យមុនប៉ុណ្ណោះវាមិនមែនមកពីអល់ឡោះឡើយ។
14 មិនដូចអ្វីដែលអ្នកគិតទេ !ក៏ប៉ុន្តែពួកគេបានប្រព្រឹត្តបទល្មើសនិងធ្វើអំពើបាបច្រើនពេករហូតដល់អំពើបាបនេះបានគ្របដណ្តប់ដួងចិត្តរបស់ពួកគេ។
15 ពិតប្រាកដណាស់ពួកគេនឹងត្រូវគេបិទបាំងពីការ មើលឃើញម្ចាស់របស់ពួកគេ

នៅថ្ងៃបរលោកនោះ។
16 ពួកគេនឹងចូលឋាននរកបន្ទាប់មកពួកគេនឹងភ្លក់រសជាតិកម្តៅភ្លើងនរក។
17 បន្ទាប់មកមានគេនិយាយថា៖ ទារុណកម្មដែលពួកអ្នកទទួលនេះហើយគឺជាអ្វី
ដែលពួកអ្នកធ្លាប់បដិសេធនឹងវានៅលើលោកិយខណៈដែលអ្នកនាំសារពួកអ្នកបាន
ប្រាប់ដល់ពួកអ្នក។

كَلَّآ إِنَّ كِتَٰبَ ٱلۡأَبۡرَارِ لَفِي عِلِّيِّينَ ١٨ وَمَآ أَدۡرَىٰكَ مَا عِلِّيُّونَ ١٩ كِتَٰبٞ مَّرۡقُومٞ ٢٠ يَشۡهَدُهُ ٱلۡمُقَرَّبُونَ ٢١
إِنَّ ٱلۡأَبۡرَارَ لَفِي نَعِيمٍ ٢٢ عَلَى ٱلۡأَرَآئِكِ يَنظُرُونَ ٢٣ تَعۡرِفُ فِي وُجُوهِهِمۡ نَضۡرَةَ ٱلنَّعِيمِ ٢٤
يُسۡقَوۡنَ مِن رَّحِيقٖ مَّخۡتُومٍ ٢٥ خِتَٰمُهُۥ مِسۡكٞۚ وَفِي ذَٰلِكَ فَلۡيَتَنَافَسِ ٱلۡمُتَنَٰفِسُونَ ٢٦
وَمِزَاجُهُۥ مِن تَسۡنِيمٍ ٢٧ عَيۡنٗا يَشۡرَبُ بِهَا ٱلۡمُقَرَّبُونَ ٢٨

18 មិនដូចអ្វីដែលគិតទេដែលថាគ្មានការជំនុំជំរះគ្មានការតបស្នងនោះ! ពិតប្រាកដ
ណាស់បញ្ជីរបស់បណ្តាអ្នកដែលសាងអំពើល្អគឺស្ថិតក្នុងអ៊ីល្លីយូន។
19 តើអ្វីដែលធ្វើឱ្យអ្នកដឹងថាអ៊ីល្លីយូនជាអ្វីនោះ?
20 គឺជាបញ្ជីមួយដែលត្រូវបានគេកត់ត្រាទុកដោយគ្មានការកែប្រែគ្មានការបន្ថែមនិង
បន្ថយឡើយ។
21 ពួកម៉ាឡាអ៊ីកាត់នាំបញ្ជីនោះមកមើលហើយនៅថ្ងៃបរលោកពួកគេធ្វើសាក្សី
ចំពោះអ្វីដែលមាននៅក្នុងបញ្ជីនោះ។
22 ពិតប្រាកដណាស់បណ្តាអ្នកដែលសាងអំពើល្អគឺស្ថិតនៅក្នុងឋានសួគ៌ណាអ៊ីម
ជារៀងរហូត។
23 ពួកគេអង្គុយលើគ្រែល្អឆើតគន់មើលភាពល្អស្អាតដែលអល់ឡោះបានរៀបចំ
សម្រាប់គេនៅក្នុងឋានសួគ៌។
24 នៅពេលអ្នកបានឃើញពួកគេអ្នកដឹងថាពួកគេជាពួកអ្នកដែលបានទទួលនូវ
លាភសក្ការៈសោយសុខនៅក្នុងឋានសួគ៌។
25 ពួកគេនឹងត្រូវគេឱ្យទទួលទានស្រាដ៏បរិសុទ្ធដែលត្រូវបានគេបោះត្រាលើវា។
26 រសជាតិចុងក្រោយរបស់វាក្រអូបដូចទឹកអប់។ នៅលើការតបស្នងដ៏ថ្លៃថ្លានេះចូរ
ពួកអ្នកដែលប្រកួតប្រជែងទាំងឡាយនាំគ្នាប្រកួតប្រជែងគ្នាចុះក្នុងរឿងនេះ។
27 ហើយស្រានោះក្រឡុកជាមួយទឹកនៅក្នុងឋានសួគ៌ជាទឹកផឹកដ៏ថ្លៃថ្នូរបំផុតនៅ
ក្នុងឋានសួគ៌។
28 គឺជាប្រភពទឹកដែលនៅក្នុងឋានសួគ៌ខ្ពស់បំផុតហើយបណ្តាអ្នកមានឋានៈ
ខ្ពង់ខ្ពស់ទទួលទានវា។ ហើយអ្នកដែលមានជំនឿក៏ទទួលទានផងដែរ។

إِنَّ ٱلَّذِينَ أَجۡرَمُواْ كَانُواْ مِنَ ٱلَّذِينَ ءَامَنُواْ يَضۡحَكُونَ ٢٩ وَإِذَا مَرُّواْ بِهِمۡ يَتَغَامَزُونَ ٣٠
وَإِذَا ٱنقَلَبُوٓاْ إِلَىٰٓ أَهۡلِهِمُ ٱنقَلَبُواْ فَكِهِينَ ٣١ وَإِذَا رَأَوۡهُمۡ قَالُوٓاْ إِنَّ هَٰٓؤُلَآءِ لَضَآلُّونَ ٣٢
وَمَآ أُرۡسِلُواْ عَلَيۡهِمۡ حَٰفِظِينَ ٣٣ فَٱلۡيَوۡمَ ٱلَّذِينَ ءَامَنُواْ مِنَ ٱلۡكُفَّارِ يَضۡحَكُونَ ٣٤
عَلَى ٱلۡأَرَآئِكِ يَنظُرُونَ ٣٥ هَلۡ ثُوِّبَ ٱلۡكُفَّارُ مَا كَانُواْ يَفۡعَلُونَ ٣٦

29 ពិតប្រាកដណាស់ពួកដែលបានប្រព្រឹត្តអំពើអាក្រក់ពួកគេធ្លាប់សើចចំអកនិង
មើលងាយដល់បណ្តាអ្នកដែលមានជំនឿ។
30 ហើយនៅពេលដែលពួកគេបានដើរកាត់បណ្តាអ្នកដែលមានជំនឿពួកគេតែងតែ
សម្តែងការចំអកឡកឡឺយ។




31 នៅពេលដែលពួកគេត្រឡប់ទៅជួបជុំគ្រួសារគេវិញពួកគេត្រលប់ទៅវិញដោយ
សប្បាយរីករាយ មានអារម្មណ៍ស្រស់ស្រាយដោយសារពួកគេបានដើរប្រមាថ
មើលងាយចំពោះពួកអ្នកមានជំនឿ។
32 ហើយនៅពេលដែលពួកគេបានឃើញបណ្ដាអ្នកដែលមានជំនឿពួកគេនិយាយ
ថា៖ពិតប្រាកដណាស់ពួកទាំងនេះជាពួកដែលវង្វេងចេញពីមាគ៌ាពិតដោយសារពួក
គេបោះបង់ចោលសាសនាដូនតា។
33 ហើយអល់ឡោះមិនបានចាត់តាំងពួកគេឱ្យឃ្លាំមើលបណ្ដាអ្នកដែលមានជំនឿ
ឡើយ។
34 ដូច្នេះនៅថ្ងៃនេះបណ្ដាអ្នកដែលមានជំនឿសើចចំអកចំពោះពួកដែលគ្មានជំនឿ
វិញដូចអ្វីដែលពួកគេបានធ្វើនៅលើលោកកិយ។
35 ពួកគេអង្គុយលើគ្រែលួផ្ចិតគន់មើលភាពល្អស្អាតដែលអល់ឡោះបានរៀបចំ
សម្រាប់គេនៅក្នុងឋានសួគ៌។
36 ពិតណាស់គេបានតបស្នងដល់ពួកប្រឆាំងនូទារុណកម្មដ៏សែនខ្លោចផ្សាលើទង្វើ
ដែលពួកគេបានប្រព្រឹត្តនៅលើលោកិយ៍។

## អាល់អ៊ិនស្ហ៊ីកក

**គោលបំណងនៃស៊ូរ៉ោះ:** របភាពនៃថ្ងៃបរលោកគឺការព្រមប្រគល់ខ្លួននៃភពទាំងឡាយ
និងការគោរពតាមបទបញ្ជារបស់ម្ចាស់និងបដិសេធពីការប្រឆាំង។

**តាហ្សៀរ**

إِذَا ٱلسَّمَآءُ ٱنشَقَّتۡ ١ وَأَذِنَتۡ لِرَبِّهَا وَحُقَّتۡ ٢ وَإِذَا ٱلۡأَرۡضُ مُدَّتۡ ٣ وَأَلۡقَتۡ مَا فِيهَا وَتَخَلَّتۡ ٤
وَأَذِنَتۡ لِرَبِّهَا وَحُقَّتۡ ٥ يَٰٓأَيُّهَا ٱلۡإِنسَٰنُ إِنَّكَ كَادِحٌ إِلَىٰ رَبِّكَ كَدۡحٗا فَمُلَٰقِيهِ ٦

1 នៅពេលដែលមេឃត្រូវបានប្រេះបែកហើយពួកម៉ាឡើអ៊ីកាត់បានចុះមក។
2 វាបានស្ដាប់បង្គាប់និងប្រតិបត្តិតាមម្ចាស់របស់វា។
3 ហើយនៅពេលដែលផែនដីត្រូវបានអល់ឡោះធ្វើឱ្យរាបស្មើ។
4 ហើយវាបានបញ្ចេញនូវសាកសពដែលមាននៅក្នុងវាហើយបោះបង់ពួកគេចោល។
5 វាបានស្ដាប់បង្គាប់និងប្រតិបត្តិតាមម្ចាស់របស់វា។
6 ឱមនុស្សលោក!ពិតប្រាកដណាស់អ្នកគឺជាអ្នកដែលខំប្រឹងប្រែងសាងចំពោះ
ម្ចាស់របស់អ្នកទោះជាអំពើល្អឬអាក្រក់អ្នកនឹងជួបទ្រង់ជាមិនខាននៅថ្ងៃបរលោក
ដើម្បីអល់ឡោះតបស្នងទៅតាមទង្វើរបស់អ្នក។

**បន្ទាប់ពីរំលឹកពីទង្វើទូទៅដែលមនុស្សបានសាងរួចគេបានបកស្រាយពីទង្វើទាំងពីរ
នេះ(ល្អនិងអាក្រក់)។**

فَأَمَّا مَنۡ أُوتِيَ كِتَٰبَهُۥ بِيَمِينِهِۦ ٧ فَسَوۡفَ يُحَاسَبُ حِسَابٗا يَسِيرٗا ٨
وَيَنقَلِبُ إِلَىٰٓ أَهۡلِهِۦ مَسۡرُورٗا ٩ وَأَمَّا مَنۡ أُوتِيَ كِتَٰبَهُۥ وَرَآءَ ظَهۡرِهِۦ ١٠ فَسَوۡفَ يَدۡعُواْ ثُبُورٗا ١١
وَيَصۡلَىٰ سَعِيرًا ١٢ إِنَّهُۥ كَانَ فِيٓ أَهۡلِهِۦ مَسۡرُورًا ١٣ إِنَّهُۥ ظَنَّ أَن لَّن يَحُورَ ١٤ بَلَىٰٓۚ إِنَّ رَبَّهُۥ كَانَ بِهِۦ بَصِيرٗا ١٥

7 សម្រាប់អ្នកដែលត្រូវបានគេប្រគល់សៀវភៅ កំណត់ហេតុរបស់គេនៅដៃស្ដាំ។
8 គេនឹងទទួលបានការកាត់ក្ដីយ៉ាងងាយស្រួលដោយគ្រាន់តែបង្ហាញនូវទង្វើដែលគេ
បានសាងហើយមិនសួរដេញដោលច្រើនឡើយ។
9 គេត្រលប់ទៅជួបជុំគ្រួសារគេវិញដោយក្ដីរីករាយ។
10 រីឯអ្នកដែលត្រូវបានគេប្រគល់នូវសៀវភៅរបស់គេនៅដៃឆ្វេងពីក្រោយខ្នងរបស់គេ។



11 គេនឹងស្រែកថា៖វិនាសអន្តរាយហើយខ្ញុំ។
12 ហើយគេនឹងចូលក្នុងឋាននរកភ្លក់នូវកម្តៅដែលឆេះយ៉ាងសន្ធោសន្ធៅ។
13 ពិតប្រាកដណាស់គេធ្លាប់រស់នៅក្នុងលោកិយជាមួយនឹងក្រុមគ្រួសាររបស់គេ
យ៉ាងសប្បាយរីករាយនូវអ្វីដែលពួកគេបានប្រឆាំងនិងបំពាន។
14 គេគិតថាគេនឹងមិនត្រូវវិលត្រឡប់ទៅរកអល់ឡោះដើម្បីទទួលការតបស្នង
បន្ទាប់ពីស្លាប់ឡើយ។
15 មិនដូច្នោះទេ ! ពិតប្រាកដណាស់ម្ចាស់របស់គេនឹងឱ្យគេត្រឡប់មកមានជីវិតវិញ
ហើយទ្រង់ដឹងបំផុតចំពោះរូបគេគ្មានអ្វីអាចលាក់បាំងទ្រង់បានឡើយ។ហើយទ្រង់
នឹងតបស្នងទៅតាមទង្វើរបស់គេ។

فَلَآ أُقۡسِمُ بِٱلشَّفَقِ ﴿١٦﴾ وَٱلَّيۡلِ وَمَا وَسَقَ ﴿١٧﴾ وَٱلۡقَمَرِ إِذَا ٱتَّسَقَ ﴿١٨﴾
لَتَرۡكَبُنَّ طَبَقًا عَن طَبَقٖ ﴿١٩﴾ فَمَا لَهُمۡ لَا يُؤۡمِنُونَ ﴿٢٠﴾ وَإِذَا قُرِئَ عَلَيۡهِمُ ٱلۡقُرۡءَانُ لَا يَسۡجُدُونَ ﴿٢١﴾
بَلِ ٱلَّذِينَ كَفَرُواْ يُكَذِّبُونَ ﴿٢٢﴾ وَٱللَّهُ أَعۡلَمُ بِمَا يُوعُونَ ﴿٢٣﴾ فَبَشِّرۡهُم بِعَذَابٍ أَلِيمٍ ﴿٢٤﴾
إِلَّا ٱلَّذِينَ ءَامَنُواْ وَعَمِلُواْ ٱلصَّٰلِحَٰتِ لَهُمۡ أَجۡرٌ غَيۡرُ مَمۡنُونِۭ ﴿٢٥﴾

16 អល់ឡោះបានស្បថនឹងពន្លឺពណ៌ក្រហមក្រោយពេលថ្ងៃលិច។
17 ទ្រង់ស្បថនឹងពេលយប់និងអ្វីប្រមូលផ្តុំក្នុងពេលយប់។
18 ទ្រង់ស្បថនឹងព្រះច័ន្ទនៅពេលវាពេញវង់។
19 ពួកអ្នកនឹងឆ្លងកាត់ពីស្ថានភាពមួយទៅស្ថានភាពមួយពីទឹកកាមទៅជាដុំឈាម
ទៅជាមានរូបរាងហើយមានជីវិតហើយបានស្លាប់ហើយក៏រស់ឡើងវិញ។
20 ហេតុអ្វីបានជាពួកអ្នកប្រឆាំងមិនព្រមជឿចំពោះអល់ឡោះនិងថ្ងៃបរលោក ?
21 ហើយនៅពេលដែលគេសូត្រគម្ពីគួរអានឱ្យពួកគេស្តាប់ពួកគេមិនព្រមស៊ូជោត
ទៅចំពោះម្ចាស់របស់ពួកគេ។
22 មិនតែប៉ុណ្ណោះពួកដែលគ្មានជំនឿថែមទាំងបដិសេធនូវអ្វីដែលអ្នកនាំសារបាន
នាំមកទៀតផង។
23 អល់ឡោះទ្រង់មហាដឹងនូវអ្វីដែលពួកគេលាក់ទុកក្នុងចិត្តរបស់ពួកគេនៃការបដិ
សេធ។គ្មានអ្វីអាចលាក់បាំងទ្រង់បានឡើយ។
24 ចូរផ្តល់ដំណឹងល្អដល់ពួកគេនូវទារុណកម្មដ៏ឈឺចាប់បំផុត។
25 លើកលែងតែបណ្តាអ្នកដែលមានជំនឿចំពោះអល់ឡោះនិងបានសាងអំពើល្អ
ត្រឹមត្រូវប៉ុណ្ណោះ។ពួកគេនឹងទទួលបានផលបុណ្យដោយឥតគណនាវាគឺឋានសួគ៌។

## អាល់ពូរូជ

**គោលបំណងនៃស៊ូរ៉ោះ**

បង្ហាញពីឧត្តមភាពនិងអនុភាពគ្រប់ទិសទីរបស់អល់ឡោះហើយការសន្យាចំពោះ
អ្នកដែលធ្វើបាបទៅលើអ្នកមានជំនឿដោយទទួលនូវទារុណកម្មយ៉ាងខ្លោចផ្សារ។

**តាហ្វសៀរ**

وَٱلسَّمَآءِ ذَاتِ ٱلۡبُرُوجِ ﴿١﴾ وَٱلۡيَوۡمِ ٱلۡمَوۡعُودِ ﴿٢﴾ وَشَاهِدٖ وَمَشۡهُودٖ ﴿٣﴾ قُتِلَ أَصۡحَٰبُ ٱلۡأُخۡدُودِ ﴿٤﴾ ٱلنَّارِ
ذَاتِ ٱلۡوَقُودِ ﴿٥﴾ إِذۡ هُمۡ عَلَيۡهَا قُعُودٞ ﴿٦﴾ وَهُمۡ عَلَىٰ مَا يَفۡعَلُونَ بِٱلۡمُؤۡمِنِينَ شُهُودٞ ﴿٧﴾ وَمَا نَقَمُواْ مِنۡهُمۡ إِلَّآ
أَن يُؤۡمِنُواْ بِٱللَّهِ ٱلۡعَزِيزِ ٱلۡحَمِيدِ ﴿٨﴾ ٱلَّذِي لَهُۥ مُلۡكُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِۚ وَٱللَّهُ عَلَىٰ كُلِّ شَيۡءٖ شَهِيدٌ





٩ إِنَّ ٱلَّذِينَ فَتَنُوا۟ ٱلْمُؤْمِنِينَ وَٱلْمُؤْمِنَٰتِ ثُمَّ لَمْ يَتُوبُوا۟ فَلَهُمْ عَذَابُ جَهَنَّمَ وَلَهُمْ عَذَابُ ٱلْحَرِيقِ ١٠

1 អល់ឡោះស្បថនឹងមេឃដែលមានផ្កាយជាច្រើនរួមទាំងព្រះអាទិត្យនិងព្រះចន្ទ។
2 ហើយទ្រង់ស្បថនឹងថ្ងៃបរលោកជាថ្ងៃដែលគេសន្យាប្រមូលផ្តុំសត្វលោកទាំងឡាយ។
3 ហើយទ្រង់ស្បថនឹងអ្នកដែលធ្វើសាក្សីដូចជាបណ្តាណាពីធ្វើសាក្សីលើប្រជាជាតិ
របស់គាត់ហើយនឹងអ្នកដែលត្រូវគេធ្វើសាក្សីឱ្យដូចជាប្រជាជាតិធ្វើសាក្សីឱ្យបណ្តា
ណាពីរបស់ពួកគេ។
4 គេបានដាក់បណ្តាសាចំពោះក្រុមដែលបានធ្វើវិនាសកម្មនៅលើផែនដីដោយពួក
គេបានជីករណ្តៅសម្រាប់អ្នកមានជំនឿ។
5 ពួកគេបានយកអុសមកបង្កាត់ភ្លើងហើយបោះអ្នកមានជំនឿចូលទាំងរស់។
6 ខណៈដែលពួកគេអង្គុយនៅជុំវិញរណ្តៅភ្លើងនោះ។
7 ដោយពួកគេសម្លឹងមើលទៅលើអ្វីដែលពួកគេកំពុងប្រព្រឹត្តទៅលើបណ្តាអ្នក
ដែលមានជំនឿដោយការគំរាមធ្វើទារុណកម្មនេះហើយពួកគេនឹងធ្វើសាក្សីលើខ្លួន
ឯងនូវអ្វីដែលពួកគេបានធ្វើ។
8 ពួកកាហ្វៀរគ្មានចងកំហឹងរឿងអ្វីជាមួយនឹងពួកគេទេក្រៅពីការមានជំនឿរបស់
ពួកគេចំពោះអល់ឡោះដែលជាម្ចាស់មហាខ្លាំងពូកែគ្មាននណាអាចឈ្នះទ្រង់ឡើយ
ហើយនិងជាទីកោតសរសើរគ្រប់ស្ថានភាពទាំងអស់។
9 ហើយទ្រង់គឺជាអ្នកគ្រប់គ្រងមេឃជាច្រើនជាន់និងផែនដី។ហើយអល់ឡោះគឺជា
សាក្សីលើទង្វើរបស់ពួកគេចំពោះពួកអ្នកមានជំនឿគ្មានអ្វីលាក់បាំងនឹងទ្រង់ឡើយ។
10 ពិតណាស់ពួកអ្នកដែលធ្វើទារុណកម្មពួកអ្នកមានជំនឿប្រុសស្រីដោយដុតនឹងភ្លើង
ដើម្បីឱ្យពួកគេចេញពីជំនឿចំពោះអល់ឡោះតែមួយគត់នោះ។បន្ទាប់មកពួកគេមិនព្រម
ទទួលសារភាពកំហុសទៅចំពោះអល់ឡោះពីបាបកម្មរបស់ពួកគេ។ពិតណាស់ពួកគេនៅ
ថ្ងៃបរលោកនឹងទទួលទារុណកម្មដ៏ខ្លោចផ្សាហើយពួកគេនឹងចូលក្នុងភ្លើងនរកដែលដុត
ពួកគេ។នេះជាការតបស្នងនូវការដុតរបស់ពួកគេទៅលើអ្នកមានជំនឿ។

إِنَّ ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ لَهُمْ جَنَّٰتٌ تَجْرِى مِن تَحْتِهَا ٱلْأَنْهَٰرُ ذَٰلِكَ ٱلْفَوْزُ ٱلْكَبِيرُ ١١
إِنَّ بَطْشَ رَبِّكَ لَشَدِيدٌ ١٢ إِنَّهُۥ هُوَ يُبْدِئُ وَيُعِيدُ ١٣ وَهُوَ ٱلْغَفُورُ ٱلْوَدُودُ ١٤ ذُو ٱلْعَرْشِ ٱلْمَجِيدُ ١٥
فَعَّالٌ لِّمَا يُرِيدُ ١٦ هَلْ أَتَىٰكَ حَدِيثُ ٱلْجُنُودِ ١٧ فِرْعَوْنَ وَثَمُودَ ١٨ بَلِ ٱلَّذِينَ كَفَرُوا۟ فِى تَكْذِيبٍ ١٩
وَٱللَّهُ مِن وَرَآئِهِم مُّحِيطٌۢ ٢٠ بَلْ هُوَ قُرْءَانٌ مَّجِيدٌ ٢١ فِى لَوْحٍ مَّحْفُوظٍۭ ٢٢

11 ពិតប្រាកដណាស់បណ្តាអ្នកដែលមានជំនឿចំពោះអល់ឡោះនិងបានសាងអំពើ
ល្អត្រឹមត្រូវនោះពួកគេនឹងទទួលបានឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោម
វិមាននិងដើមឈើពួកគេ។នោះគឺជារង្វាន់ដែលគេរៀបចំសម្រាប់ពួកគេហើយនោះគឺ
ជាជោគជ័យដ៏ធំធេង។
12 ពិតប្រាកដណាស់ទារុណកម្មរបស់ម្ចាស់អ្នក( មូហាំម៉ាត់ )ចំពោះពួកអ្នកបំពាន
និងជិះជាន់គេគឺខ្លាំងក្លាជាទីបំផុត។
13 ទ្រង់បានបង្កើតសត្វលោកឱ្យកើតមកក្នុងលោកីយ៍ ហើយទ្រង់ឱ្យពួកគេរស់ឡើង
វិញក្រោយពេលស្លាប់។
14 ទ្រង់មហាអភ័យទោសដល់កំហុសខ្ញុំរបស់ទ្រង់ដែលមានជំនឿ។ហើយទ្រង់មហា
អាណិតស្រលាញ់ចំពោះពួកអ្នកដែលគោរពប្រតិបត្តិនិងកោតខ្លាច។
15 ទ្រង់ជាម្ចាស់នៃអារ៉ស្ហ៍ដ៏ថ្កុំថ្កើង។

16 ជាម្ចាស់ដែលធ្វើតាមអ្វីដែលទ្រង់មានចេតនាក្នុងការអភ័យទោសដល់អ្នកដែល
ទ្រង់សព្វព្រះទ័យនិងធ្វើទារុណកម្មចំពោះអ្នកដែលទ្រង់មានចេតនា។
17 តើរឿងរបស់កងទ័ពដែលធ្វើសង្គ្រាមប្រឆាំងនឹងភាពត្រឹមត្រូវបានមកដល់អ្នក(មូ
ហាំម៉ាត់)ឬទេ?
18 ដូចជាហ្វៀរអោននិងសាមូដជាប្រជាជាតិណាពីសរទេ្យះ។
19 គ្មានអ្វីហាមឃាត់ពួកគេពីការមានជំនឿដោយសារពួកគេមិនបានដឹងពីរឿងរ៉ាវអ្នក
ជំនាន់មុននិងការវិនាសរបស់ពួកគេទេផ្ទុយទៅវិញពួកដែលគ្មានជំនឿនៅតែព្យាយាម
បដិសេធនូវអ្វីដែលអ្នកនាំសារពួកគេបាននាំមកហើយធ្វើតាមចំណង់របស់ពួកគេ។
20 ហើយអល់ឡោះដឹងរាល់សកម្មភាពរបស់ពួកគេទាំងអស់។គ្មានអ្វីអាចគេចផុតពី
ទ្រង់បានឡើយ។
21 គម្ពីរគួរអានមិនមែនជាកំណាព្យដូចដែលពួបដិសេធនិយាយឡើយផ្ទុយទៅវិញវា
ជាគម្ពីរដ៏មហាថ្កុំថ្កើងមហាឧត្តុង្គឧត្តម។
22 ដែលមានថាវរនៅក្នុងបញ្ជីកំណត់ត្រា(ឡាវហុលម៉ះហ្វ៊ូស)ដែលត្រូវបានថែរក្សា
ដោយគ្មានការកែប្រែបន្ថែមបន្ថយឡើយ។

# អាត់តរិក

**គោលបំណងនៃស៊ូរ៉ោះ**បង្ហាញពីការគ្រប់គ្រងយ៉ាងច្បាស់លាស់របស់អល់ឡោះនិង
សមត្ថភាពដ៏អស្ចារ្យរបស់ទ្រង់។

**តាហ្វសៀរ**

وَٱلسَّمَآءِ وَٱلطَّارِقِ ١ وَمَآ أَدۡرَىٰكَ مَا ٱلطَّارِقُ ٢ ٱلنَّجۡمُ ٱلثَّاقِبُ ٣ إِن كُلُّ نَفۡسٖ لَّمَّا عَلَيۡهَا حَافِظٞ ٤
فَلۡيَنظُرِ ٱلۡإِنسَٰنُ مِمَّ خُلِقَ ٥ خُلِقَ مِن مَّآءٖ دَافِقٖ ٦ يَخۡرُجُ مِنۢ بَيۡنِ ٱلصُّلۡبِ وَٱلتَّرَآئِبِ ٧
إِنَّهُۥ عَلَىٰ رَجۡعِهِۦ لَقَادِرٞ ٨ يَوۡمَ تُبۡلَى ٱلسَّرَآئِرُ ٩ فَمَا لَهُۥ مِن قُوَّةٖ وَلَا نَاصِرٖ ١٠

1 អល់ឡោះបានស្បថនឹងមេឃនិងផ្កាយដែលបញ្ចេញរស្មីនៅពេលរាត្រី។
2 តើអ្វីដែលធ្វើឱ្យអ្នកដឹងថាផ្កាយដ៏អស្ចារ្យជាអ្វីនោះ?
3 វាគឺជាផ្កាយដែលមានសន្ទះពន្លឺភ្លឺចិញ្ចាច។
4 ជីវិតគ្រប់រូបសុទ្ធតែត្រូវបានអល់ឡោះឱ្យម៉ាឡាអ៊ីកាត់ថែរក្សាព្រមទាំងពាក្យសម្តី
និងទង្វើរបស់គេដើម្បីទុកជំនុំជំរះនៅថ្ងៃបរលោក។
5 ដូច្នេះចូរឱ្យមនុស្សលោកពិចារណានូវអ្វីដែលអល់ឡោះបានបង្កើត។ដើម្បីឱ្យពួកគេ
បានដឹងពីសមត្ថភាពដ៏អស្ចារ្យរបស់អល់ឡោះនិងការអសមត្ថភាពរបស់មនុស្សលោក។
6 អល់ឡោះបានបង្កើតគេមកពីទឹកកាមមនុស្សប្រុសបញ្ចូលក្នុងស្បូនមនុស្សស្រី។
7 ទឹកនេះហូរចេញពីឆ្អឹងខ្នងរបស់បុរសនិងឆ្អឹងជំនីររបស់ស្ត្រី។
8 ពិតប្រាកដណាស់ទ្រង់អាចបង្កើតគេពីទឹកកាមដំបូងនៅពេលឡើងនោះហើយទ្រង់ពិត
ជាមានអានុភាពក្នុងការធ្វើឱ្យគេរស់ឡើងវិញបន្ទាប់ពីស្លាប់ដើម្បីជំនុំជំរះ។
9 នៅថ្ងៃដែលអាថ៌កំបាំងទាំងអស់ត្រូវបានលាតត្រដាង។លាតត្រដាងពីអ្វីដែល
លាក់កំបាំងនៅក្នុងចិត្តនៃគោលជំនឿនិងបំណងប្រាថ្នានិងផ្សេងៗទៀត។នៅពេល
នោះគេអាចបែងចែករវាងប្រការល្អនិងប្រការអាក្រក់។
10 នៅពេលនោះមនុស្សអសមត្ថភាពការពារខ្លួនពីទារុណកម្មរបស់អល់ឡោះ។
ហើយក៏គ្មានអ្នកជួយសង្គ្រោះគេឱ្យរួចពីទារុណកម្មដែរ។

وَٱلسَّمَآءِ ذَاتِ ٱلرَّجۡعِ ١١ وَٱلۡأَرۡضِ ذَاتِ ٱلصَّدۡعِ ١٢ إِنَّهُۥ لَقَوۡلٞ فَصۡلٞ ١٣ وَمَا هُوَ بِٱلۡهَزۡلِ ١٤
إِنَّهُمۡ يَكِيدُونَ كَيۡدٗا ١٥ وَأَكِيدُ كَيۡدٗا ١٦ فَمَهِّلِ ٱلۡكَٰفِرِينَ أَمۡهِلۡهُمۡ رُوَيۡدَۢا ١٧





(11) អល់ឡោះស្បថនឹងមេឃដែលពោពេញដោយទឹកភ្លៀង។ពីព្រោះវាធ្លាក់ចុះមក
ហើយត្រលប់ទៅវិញជាវដ្តទឹកភ្លៀង។
(12) ហើយទ្រង់ស្បថនឹងផែនដីដែលមានស្នាមប្រេះដុះចេញជាដំណាំ ផ្លែឈើ និងរុក្ខ
ជាតិផ្សេងៗ។
(13) ពិតប្រាកដណាស់គម្ពីរគួរអានដែលបញ្ចុះមកឱ្យណាពីម៉ូហាំម៉ាត់គឺជាពាក្យដែល
វែកញែករវាងត្រូវនិងខុសការពិតនិងកុហក។
(14) ហើយគម្ពីរគួរអានក៏មិនមែនសម្រាប់លេងសើចដែរ។ផ្ទុយទៅវិញវាគឺជាការពិត។
(15) ពិតណាស់ពួកដែលបដិសេធនូវអ្វីដែលរ៉ស៊ូលនាំមកបានប្រើកលល្បិចជាច្រើន
ដើម្បីប្រឆាំងនឹងអ្វីដែលរ៉ស៊ូលបាននាំមកនៃសាសនាពិត។
(16) ហើយយើងក៏មានផែនការតបតនឹងពួកគេវិញដើម្បីបង្ហាញពីសាសនាពិតនិង
ប្រឆាំងនឹងប្រការមិនពិត។
(17) ដូច្នេះចូរអ្នក( មូហាំម៉ាត់ )ពន្យារពេលឱ្យពួកគ្មានជំនឿនិងរង់ចាំមើលពួកគេមួយរ
យៈសិនចុះកុំទាន់ប្រញាប់ឱ្យពួកគេទទួលទារុណកម្មនិងវិនាសអី។

# អាល់អាក់ឡា

**គោលបំណងនៃស៊ូរ៉ោះ**

ការរំលឹកខ្លួនពីលាភសក្ការៈដែលអល់ឡោះបានផ្តល់ឱ្យនិងទំនាក់ទំនងរបស់វាជាមួយនឹង
ជីវិតនៅថ្ងៃបរលោកហើយនិងការជំរះខ្លួនពីការជាប់ពាក់ព័ន្ធនៅលោកិយ៍។

**តាហ្វសៀរ**

سَبِّحِ ٱسۡمَ رَبِّكَ ٱلۡأَعۡلَى ١ ٱلَّذِي خَلَقَ فَسَوَّىٰ ٢ وَٱلَّذِي قَدَّرَ فَهَدَىٰ ٣ وَٱلَّذِيٓ أَخۡرَجَ ٱلۡمَرۡعَىٰ ٤
فَجَعَلَهُۥ غُثَآءً أَحۡوَىٰ ٥ سَنُقۡرِئُكَ فَلَا تَنسَىٰٓ ٦ إِلَّا مَا شَآءَ ٱللَّهُۚ إِنَّهُۥ يَعۡلَمُ ٱلۡجَهۡرَ وَمَا يَخۡفَىٰ ٧
وَنُيَسِّرُكَ لِلۡيُسۡرَىٰ ٨ فَذَكِّرۡ إِن نَّفَعَتِ ٱلذِّكۡرَىٰ ٩ سَيَذَّكَّرُ مَن يَخۡشَىٰ ١٠
وَيَتَجَنَّبُهَا ٱلۡأَشۡقَى ١١ ٱلَّذِي يَصۡلَى ٱلنَّارَ ٱلۡكُبۡرَىٰ ١٢ ثُمَّ لَا يَمُوتُ فِيهَا وَلَا يَحۡيَىٰ ١٣

(1) ចូរលើកតម្កើងម្ចាស់របស់អ្នកដែលខ្ពង់ខ្ពស់លើម៉ាខឡូកទាំងឡាយដោយសូត្រ
នាមនៃម្ចាស់របស់អ្នកដ៏ឧត្តុង្គឧត្តមចុះ។
(2) ទ្រង់ជាអ្នកបង្កើតមនុស្សឱ្យមានលក្ខណៈសមរម្យ។
(3) ទ្រង់បានកំណត់អម្បូរនៃអ្វីគ្រប់យ៉ាងមានប្រភេទនិងលក្ខណៈសម្បត្តិរបស់វា។
ហើយផ្តល់ការចង្អុលបង្ហាញឱ្យពួកគេនូវអ្វីដែលសាកសម្បជាមួយពួកគេ។
(4) និងជាអ្នកដែលបណ្តុះរុក្ខជាតិបៃតងពីក្នុងដីដើម្បីចិញ្ចឹមសត្វពាហនៈរបស់ពួកអ្នក។
(5) បន្ទាប់ពីមានពណ៌បៃតងស្រស់ទ្រង់បានធ្វើឱ្យក្រៀមស្វិតស្រពោនក្លាយជាពណ៌
ខ្មៅ។
(6) យើងនឹងសូត្រគម្ពីរគួរអានឱ្យអ្នកស្តាប់។ហើយអ្នកមិនត្រូវប្រញាប់ប្រញាលសូត្រ
តាមជីព្រីលដោយសារតែខ្លាចភ្លេចឡើយព្រោះយើងបានប្រមូលវាដាក់ក្នុងទ្រូងរបស់
អ្នកដោយមិនភ្លេចឡើយ។
(7) លើកលែងតែអ្វីដែលអល់ឡោះទ្រង់សព្វព្រះទ័យឱ្យគាត់ភ្លេចប៉ុណ្ណោះ។ពិតណាស់
ទ្រង់ដឹងនូវអ្វីដែលលាតត្រដាងនិងលាក់កំបាំងគ្មានអ្វីអាចលាក់បាំងទ្រង់បានឡើយ។
(8) ហើយយើងនឹងសម្រួលដល់អ្នកនូវកិច្ចការដែលអល់ឡោះសព្វព្រះទ័យអំពីកិច្ច
ការដែលនាំឱ្យបានចូលឋានសួគ៌។
(9) ចូរទូន្មានមនុស្សតាមអ្វីដែលយើងបានផ្តល់វាំហើយឱ្យអ្នកអំពីគម្ពីគួរអាននិងរំលឹង
ពួកគេចុះប្រសិនបើការក្រើនរំលឹកនោះមានផលប្រយោជន៍ ។



10 គេនឹងទទួលយកការទូន្មានរបស់អ្នកបើគេជាអ្នកកោតខ្លាចអល់ឡោះ។ហើយការទូន្មាននេះធ្វើឱ្យគេកាន់តែកោតខ្លាចនិងកាន់តែប្រសើរ។
11 ពួកអ្នកការហៀរបានរត់គេចពីការទូន្មាននេះ។ពីព្រោះពួកគេគឺមនុស្សដែលអពមង្គលបំផុតនៅក្នុងថ្ងៃបរលោកដោយបានចូលឋាននរក៍។
12 គឺជាអ្នកដែលនឹងត្រូវចូលទៅក្នុងភ្លើងនរកយ៉ាងធំធេងសាកនូវកម្តៅរបស់វាហើយទទួលរងការលំបាកជារៀងរហូត។
13 បន្ទាប់មកពួកគេនឹងស្ថិតក្នុងឋាននរកជារៀងរហូតហើយនឹងត្រូវទទួលទារុណកម្មរហូតដោយគ្មានការស្លាប់ដើលអាចសម្រាកពីទារុណកម្ម។ហើយក៏មិនរស់ដោ យក្តីសុខដែរ។

قَدۡ أَفۡلَحَ مَن تَزَكَّىٰ ١٤ وَذَكَرَ ٱسۡمَ رَبِّهِۦ فَصَلَّىٰ ١٥ بَلۡ تُؤۡثِرُونَ ٱلۡحَيَوٰةَ ٱلدُّنۡيَا ١٦
وَٱلۡأٓخِرَةُ خَيۡرٞ وَأَبۡقَىٰٓ ١٧ إِنَّ هَٰذَا لَفِي ٱلصُّحُفِ ٱلۡأُولَىٰ ١٨ صُحُفِ إِبۡرَٰهِيمَ وَمُوسَىٰ ١٩

14 ពិតណាស់អ្នកដែលជ្រះស្អាតពីប្រការស្ទីរិកនិងអបាយមុខគឺជាអ្នកដែលទទួលបានជោគជ័យ។
15 ហើយគេបានរំលឹកនាមនៃម្ចាស់របស់គេទៅតាមច្បាប់បានកំណត់។ហើយនិងប្រតិបត្តិសឡាតទៅតាមលក្ខណៈដែលគេត្រូវការ។
16 ផ្ទុយទៅវិញពួកអ្នកប្រែរជ្វាស្រឡាញ់ការរស់នៅក្នុងលោកិយខ្លាំងជាងជីវិតនៅថ្ងៃបរលោកខណៈដែលវាទាំងពីរមានភាពខុសគ្នាយ៉ាងខ្លាំង។
17 ហើយថ្ងៃបរលោកវាល្អប្រសើរជាងលោកីយ៍និងអ្វីៗដែលមានក្នុងវាទាំងសេចក្តីសុខសុភមង្គលជាអមតៈ។ពីព្រោះគេទទួលបានលាភសក្ការៈដោយគ្មានដាច់ឡើយ។
18 អ្វីដែលបានលើកឡើងប្រាប់ដល់ពួកអ្នកអំពីបទបញ្ញានិងដំណឹងទាំងនោះគឺមានចារនៅក្នុងគម្ពីរមុនៗ។
19 គឺគម្ពីរដែលបានបញ្ចុះឱ្យណាពីអ៊ីព្រហ៊ីមនិងណាពីមូសា។

## អាល់ហ្គាស្ហ៊ីយ៉ះ

**គោលបំណងនៃស៊ូរ៉ោះ**៖រំលឹកជីវិតដោយមើលលើសមត្ថភាពរបស់អល់ឡោះក្នុងការធ្វើទារុណកម្មនិងការផ្តល់លាភសក្ការៈ។ហើយភស្តុតាងរបស់វាគឺមាននៅក្នុងអាយ៉ាត់ៗនេះ។ដើម្បីបំពេញជីវិតនូវបំណងប្រាថ្នានិងភាពភ័យខ្លាច។

**តាហ្វសៀរ**

هَلۡ أَتَىٰكَ حَدِيثُ ٱلۡغَٰشِيَةِ ١ وُجُوهٞ يَوۡمَئِذٍ خَٰشِعَةٌ ٢ عَامِلَةٞ نَّاصِبَةٞ ٣ تَصۡلَىٰ نَارًا حَامِيَةٗ ٤
تُسۡقَىٰ مِنۡ عَيۡنٍ ءَانِيَةٖ ٥ لَّيۡسَ لَهُمۡ طَعَامٌ إِلَّا مِن ضَرِيعٖ ٦ لَّا يُسۡمِنُ وَلَا يُغۡنِي مِن جُوعٖ ٧

1 តើដំណឹងនៃថ្ងៃបរលោកបានមកដល់អ្នក( មូហាំម៉ាត់ )ហើយឬនៅ ?ជាថ្ងៃដែលមនុស្សលោកភ័យរន្ធត។
2 នៅថ្ងៃបរលោកមនុស្សចែកជាពីរក្រុមមួយជាក្រុមក្រៀមក្រំសោកសៅមួយទៀតជាក្រុមសប្បាយរីករាយ។ហើយអ្នកដែលក្រៀមក្រំសោកសៅទឹកមុខរបស់គេគឺមានភាពអាម៉ាស់។
3 ពួកគេនឿយហត់និងរវល់យ៉ាងខ្លាំង។
4 អ្នកដែលមានទឹកមុខបែបនោះពួកគេនឹងចូលក្នុងភ្លើងនរកដ៏សែនក្តៅ។
5 គេចាក់ទឹកដ៏សែនក្តៅឱ្យពួកគេផឹក។
6 គ្មានចំណីអាហារណាសម្រាប់ពួកគេឡើយក្រៅពីអាហារដ៏អាក្រក់វាជាប្រភេទរុក្ខជាតិបន្លាដែលគេហៅថាស្ទីពរីកនៅពេលដែលវាស្ងួតវាក្លាយជាជាតិពុល។




7 ហើយអ្នកដែលបានហូបវាគឺមិនបានធ្វើឱ្យធំធាត់ និងមិនធ្វើឱ្យបាត់ការស្រេកឃ្លាន
នោះឡើយ។

وُجُوهٌ يَوۡمَئِذٖ نَّاعِمَةٞ ٨ لِّسَعۡيِهَا رَاضِيَةٞ ٩ فِي جَنَّةٍ عَالِيَةٖ ١٠ لَّا تَسۡمَعُ فِيهَا لَٰغِيَةٗ ١١ فِيهَا عَيۡنٞ
جَارِيَةٞ ١٢ فِيهَا سُرُرٞ مَّرۡفُوعَةٞ ١٣ وَأَكۡوَابٞ مَّوۡضُوعَةٞ ١٤ وَنَمَارِقُ مَصۡفُوفَةٞ ١٥ وَزَرَابِيُّ مَبۡثُوثَةٌ ١٦

8 ហើយទឹកមុខអ្នកដែលសប្បាយរីករាយនៅថ្ងៃនោះគឺពោពេញទៅដោយភាព
ស្រស់ស្រាយនិងរីករាយ។
9 ដោយសារពួកគេពេញចិត្តចំពោះភាពខិតខំប្រឹងប្រែងរបស់ខ្លួនកាលនៅលោកី
យ៍។ពីព្រោះគេទទួលបានផលបុណ្យដ៏ជាទីគាប់ចិត្ត។
10 នៅក្នុងឋានសួគ៌ដ៏ខ្ពង់ខ្ពស់។
11 ដែលនៅក្នុងឋានសួគ៌នោះពួកគេមិនលឺពាក្យសំដីឥតបានការពាក្យឥត
ប្រយោជន៍ឡើយជាពិសេសគឺសំដីហារ៉ាម។
12 នៅក្នុងឋានសួគ៌មានប្រភពទឹកដែលហូរកាត់តាមវា។ហើយពួកគេអាចប្រើប្រាស់
តាមចិត្តចង់។
13 នៅទីនោះមានគ្រែខ្ពស់ៗ។
14 និងកែវដែលបានរៀបចំទុកដាក់ជាស្រេចសម្រាប់យកមកពិសារ។
15 និងខ្នើយកើយដែលរៀបដាក់ជាជួរ។
16 និងកម្រាលព្រំដែលបានក្រាលសន្ធឹងរួចជាស្រេចគ្រប់ទីកន្លែង។

**បន្ទាប់ពីអល់ឡោះបានរៀបរាប់ពីភាពខុសគ្នារវាងអ្នកក្រៀមក្រំសោកសៅនិងអ្នកសប្បាយ
រីករាយនៅថ្ងៃបរលោករួចទ្រង់បានបង្វែរអ្នកការហ្វេរឱ្យមើលអ្វីដែលបញ្ជាក់ពីភាពខ្លាំង
ពូកែរបស់ម្ចាស់បង្កើតមនុស្សលោកនិងការបង្កើតដ៏ល្អប្រពៃរបស់ទ្រង់ដើម្បីជាភស្តុតាងឱ្យ
ពួកគេមានជំនឿនិងបានចូលក្នុងឋានសួគ៌ហើយក្លាយជាអ្នកសប្បាយរីករាយ។**

أَفَلَا يَنظُرُونَ إِلَى ٱلۡإِبِلِ كَيۡفَ خُلِقَتۡ ١٧ وَإِلَى ٱلسَّمَآءِ كَيۡفَ رُفِعَتۡ ١٨
وَإِلَى ٱلۡجِبَالِ كَيۡفَ نُصِبَتۡ ١٩ وَإِلَى ٱلۡأَرۡضِ كَيۡفَ سُطِحَتۡ ٢٠

17 តើពួកគេមិនសង្កេតមើលទៅសត្វអូដ្ឋទេឬ តើអល់ឡោះបង្កើតវាយ៉ាងដូចម្ដេច?
ហើយនិងការជ្រើសរើសសម្រាប់កូនចៅនីអាដាំ។
18 និងមើលទៅមេឃតើវាត្រូវបានគេលើកឱ្យខ្ពស់ឡើងរហូតក្លាយជាដំបូលដោយ
មិនធ្លាក់មកវិញយ៉ាងដូចម្ដេច?
19 និងមើលទៅភ្នំទាំងឡាយតើវាត្រូវបានគេបោះភ្ជាប់និងដីយ៉ាងរឹងមាំដើម្បីទប់ទ
ល់នឹងការរញ្ជួយដីដូចម្ដេច ?
20 និងមើលទៅផែនដីតើវាត្រូវបានគេពន្លាតសន្ធឹងនិងផ្ដល់ភាពងាយស្រួលដល់
មនុស្សក្នុងការរស់នៅយ៉ាងដូចម្ដេច?

**បន្ទាប់ពីទ្រង់បានបង្វែពួកគេឱ្យមើលនូវសមត្ថភាពរបស់ទ្រង់ក្នុងការបង្កើតរួចទ្រង់
បានបង្វែមកអ្នកនាំសាររបស់ទ្រង់វិញ។**

فَذَكِّرۡ إِنَّمَآ أَنتَ مُذَكِّرٞ ٢١ لَّسۡتَ عَلَيۡهِم بِمُصَيۡطِرٍ ٢٢ إِلَّا مَن تَوَلَّىٰ وَكَفَرَ ٢٣
فَيُعَذِّبُهُ ٱللَّهُ ٱلۡعَذَابَ ٱلۡأَكۡبَرَ ٢٤ إِنَّ إِلَيۡنَآ إِيَابَهُمۡ ٢٥ ثُمَّ إِنَّ عَلَيۡنَا حِسَابَهُم ٢٦

21 ដូច្នេះចូរអ្នក(មូហាំម៉ាត់)ក្រើនរំលឹកនិងបំភ័យពួកគេពីទារុណកម្មរបស់អល់ឡោះ
ចុះ។ការពិតអ្នក គ្រាន់តែជាអ្នកដែលក្រើនរំលឹកប៉ុណ្ណោះ។គេមិនទាមទាអ្វីពីអ្នកក្រៅពី
ការរំលឹកឡើយ។



22 អ្នកគ្មានសិទ្ធិបង្ខំឱ្យពួកគេមានជំនឿឡើយ។
23 ក៏ប៉ុន្តែអ្នកណាដែលងាកចេញនិងគ្មានជំនឿ។ហើយប្រឆាំងចំពោះអល់ឡោះនិងរ៉សូលរបស់ទ្រង់។
24 នៅថ្ងៃបរលោកអល់ឡោះនឹងដាក់ទារុណកម្មគេដ៏ធ្ងន់ធ្ងរបំផុតគឺនៅក្នុងនរកចាហាន់ណាំជារៀងរហូត។
25 ពិតប្រាកដណាស់ការវិលត្រឡប់របស់ពួកគេបន្ទាប់ពីស្លាប់គឺមកកាន់យើង( អល់ឡោះ )តែម្នាក់គត់។
26 បន្ទាប់មកយើងជាអ្នកជំនុំជម្រះពួកគេហើយយើងនឹងតបស្នងឱ្យពួកគេតាមទង្វើរបស់ពួកគេ។

## អាល់ហ្វាច់រ៍

**គោលបំណងនៃស៊ូរ៉ោះ**

ការបង្ហាញឱ្យឃើញពីភាពអស្ចារ្យនិងសមត្ថភាពរបស់ព្រះអល់ឡោះលើការគ្រប់គ្រងភពនិងស្ថានភាពមនុស្សហើយនិងលទ្ធផលចុងក្រោយនៃពួកអ្នកបំពាន។

**តាហ្វសៀរ**

وَٱلۡفَجۡرِ ١ وَلَيَالٍ عَشۡرٖ ٢ وَٱلشَّفۡعِ وَٱلۡوَتۡرِ ٣ وَٱلَّيۡلِ إِذَا يَسۡرِ ٤ هَلۡ فِي ذَٰلِكَ قَسَمٞ لِّذِي حِجۡرٍ ٥
أَلَمۡ تَرَ كَيۡفَ فَعَلَ رَبُّكَ بِعَادٍ ٦ إِرَمَ ذَاتِ ٱلۡعِمَادِ ٧ ٱلَّتِي لَمۡ يُخۡلَقۡ مِثۡلُهَا فِي ٱلۡبِلَٰدِ ٨
وَثَمُودَ ٱلَّذِينَ جَابُواْ ٱلصَّخۡرَ بِٱلۡوَادِ ٩ وَفِرۡعَوۡنَ ذِي ٱلۡأَوۡتَادِ ١٠ ٱلَّذِينَ طَغَوۡاْ فِي ٱلۡبِلَٰدِ ١١
فَأَكۡثَرُواْ فِيهَا ٱلۡفَسَادَ ١٢ فَصَبَّ عَلَيۡهِمۡ رَبُّكَ سَوۡطَ عَذَابٍ ١٣ إِنَّ رَبَّكَ لَبِٱلۡمِرۡصَادِ ١٤

1 អល់ឡោះស្បថនឹងពេលទៀបភ្លឺ។
2 ហើយទ្រង់ស្បថនឹងយប់ទាំងដប់( ដប់ថ្ងៃដំបូងនៃខែហ្ស៊ុលហិជ្ជះ )។
3 ហើយទ្រង់ស្បថនឹងចំនួនគូនិងចំនួនសេស។
4 ហើយទ្រង់ស្បថនឹងពេលយប់ពេលវាមកដល់ហើយក៏បានកន្លងផុតទៅ។ចំលើយនៃការស្បថទាំងនេះគឺការតបស្នងទៅតាមទង្វើរបស់ពួកអ្នក។
5 តើការស្បថនៅក្នុងរឿងទាំងនេះមិនគ្រប់គ្រាន់សម្រាប់អ្នកដែលស្វែងយល់ទេឬ?
6 តើអ្នក( មូហាំម៉ាត់ )មិនបានឃើញទេឬម្ចាស់របស់អ្នកបានធ្វើដូចម្តេចចំពោះក្រុមអាដជាក្រុមណាពីហ៊ូទនៅពេលដែលពួកគេបដិសេធនឹងអ្នកនាំសាររបស់ពួកគេ។
7 និងកុលសម្ព័ន្ធអ៊ីរ៉ំមដែលជាបុព្វបុរសរបស់ក្រុមអាដដែលបួនរ្យល់សំណង់ខ្ពស់ៗ។
8 ដែលអល់ឡោះមិនបានបង្កើតអ្វីដូចវាឡើយនៅលើផែនដីនេះ។
9 តើអ្នកមិនបានឃើញទេឬម្ចាស់របស់អ្នកបានធ្វើដូចម្តេចចំពោះក្រុមសាមូតជាក្រុមណាពីសទ្បេះ។ពួកគេបានដាប់ថ្មភ្នំធ្វើជាលំនៅដ្ឋាន។
10 តើអ្នកមិនបានឃើញទេឬម្ចាស់របស់អ្នកបានធ្វើដូចម្តេចចំពោះហ្វៀរអោនដែលមានពលទាហានជាអ្នកធ្វើទារុណកម្មលើមនុស្សលោក?
11 ពួកគេទាំងអស់នោះជាពួកដែលបានបំពាននៅលើផែនដីនេះ។
12 ពួកគេបង្កការបំផ្លិចបំផ្លាញច្រើនក្នុងប្រទេសដោយអំពើអាបាយមុខនិងការប្រឆាំងចំពោះអល់ឡោះ។
13 អល់ឡោះបានទម្លាក់លើពួកគេនូវទារុណកម្ម ដ៏ឈឺចាប់ជាការពិន័យលើពួកគេ។
14 ពិតណាស់ម្ចាស់របស់អ្នកទ្រង់ឃ្លាំមើលគ្រប់ទង្វើរបស់មនុស្សដើម្បីតបស្នងឱ្យគេ។បើល្អទទួលបានឋានសួគ៌បើអាក្រក់ទទួលបានឋាននរក។




فَأَمَّا ٱلۡإِنسَٰنُ إِذَا مَا ٱبۡتَلَىٰهُ رَبُّهُۥ فَأَكۡرَمَهُۥ وَنَعَّمَهُۥ فَيَقُولُ رَبِّيٓ أَكۡرَمَنِ ١٥ وَأَمَّآ إِذَا مَا ٱبۡتَلَىٰهُ فَقَدَرَ
عَلَيۡهِ رِزۡقَهُۥ فَيَقُولُ رَبِّيٓ أَهَٰنَنِ ١٦ كَلَّاۖ بَل لَّا تُكۡرِمُونَ ٱلۡيَتِيمَ ١٧ وَلَا تَحَٰٓضُّونَ عَلَىٰ طَعَامِ
ٱلۡمِسۡكِينِ ١٨ وَتَأۡكُلُونَ ٱلتُّرَاثَ أَكۡلٗا لَّمّٗا ١٩ وَتُحِبُّونَ ٱلۡمَالَ حُبّٗا جَمّٗا ٢٠

15 រីឯមនុស្សលោកនៅពេលដែលម្ចាស់របស់គេបានសាកល្បងគេដោយបានលើកតម្កើងនិងប្រទាននៀកម៉ាត់ដល់គេនោះ។គេនឹងនិយាយថា៖ម្ចាស់របស់ខ្ញុំជាអ្នកដែលបានលើកតម្កើងខ្ញុំ។

16 ប៉ុន្តែនៅពេលដែលទ្រង់សាកល្បងគេដោយបានក្បិតក្បៀតនូវលាភសក្ការៈរបស់ទ្រង់ចំពោះគេនោះ។គេនឹងនិយាយថា៖ម្ចាស់របស់ខ្ញុំធ្វើឱ្យខ្ញុំទទួលនូវភាពអាម៉ាស់។

17 មិនដូចអ្វីដែលពួកអ្នកគិតឡើយថាការប្រទាននៀកម៉ាត់ជាសញ្ញាថាអល់ឡោះលើកតម្កើងហើយការក្បិតក្បៀតនូវលាភសក្ការៈជាសញ្ញាថាអល់ឡោះមិនពេញចិត្តឡើយ។ផ្ទុយទៅវិញតាមពិតគឺដោយសារពួកអ្នកលើកតម្កើងក្មេងកំព្រានូវអ្វីដែលអល់ឡោះបានផ្តល់ឱ្យអ្នក។

18 ហើយពួកអ្នកមិនជំរុញគ្នាឱ្យបរិច្ចាគទ្រព្យដល់អ្នកទីទាល់ក្រ។

19 ហើយពួកអ្នកកេងប្រវ័ញ្ចទ្រព្យរបស់កូនកំព្រា ស្ត្រីភេទនិងពួកអ្នកទន់ខ្សោយយ៉ាងខ្លាំងក្លា។

20 ហើយពួកអ្នកថែមទាំងស្រឡាញ់ទ្រព្យសម្បត្តិហួសហេតុដោយមិនព្រមបរិច្ចាកលើមាគ៌ាអល់ឡោះឡើយ។

كَلَّآۖ إِذَا دُكَّتِ ٱلۡأَرۡضُ دَكّٗا دَكّٗا ٢١ وَجَآءَ رَبُّكَ وَٱلۡمَلَكُ صَفّٗا صَفّٗا ٢٢ وَجِاْيٓءَ يَوۡمَئِذِۭ بِجَهَنَّمَۚ
يَوۡمَئِذٖ يَتَذَكَّرُ ٱلۡإِنسَٰنُ وَأَنَّىٰ لَهُ ٱلذِّكۡرَىٰ ٢٣ يَقُولُ يَٰلَيۡتَنِي قَدَّمۡتُ لِحَيَاتِي ٢٤ فَيَوۡمَئِذٖ
لَّا يُعَذِّبُ عَذَابَهُۥٓ أَحَدٞ ٢٥ وَلَا يُوثِقُ وَثَاقَهُۥٓ أَحَدٞ ٢٦ يَٰٓأَيَّتُهَا ٱلنَّفۡسُ ٱلۡمُطۡمَئِنَّةُ ٢٧

21 ពួកអ្នកមិនគួរណាធ្វើអ៊ីចឹងនោះទេ។ចូរនឹកគិតនៅពេលដែលផែនដីរញ្ជួយនិងរង្គោះរង្គើយ៉ាងខ្លាំង។

22 ហើយម្ចាស់របស់អ្នកទ្រង់យាងមកកាត់ក្តីសត្វលោករបស់ទ្រង់។ពួកម៉ាឡាអ៊ីកាត់ក៏បានមកដល់ដោយតម្រៀបជាជួរ។

23 ហើយនៅថ្ងៃនោះនរកជើហាន់ណាំត្រូវបានគេនាំមក។នៅថ្ងៃនោះដែរមនុស្សលោកនឹងភ្ញាក់រលឹក។តើគេមានការភ្ញាក់រលឹកយ៉ាងដូចម្តេចបើនោះជាថ្ងៃជំនុំជំរះមិនមែនជាថ្ងៃសាងតង្វើឡើយ?

24 គេនឹងនិយាយទាំងសោកស្តាយថា៖ឱអនិច្ចាខ្លួនខ្ញុំអើយ!ខ្ញុំគួរតែបានសាងអំពើល្អសម្រាប់ខ្លួនខ្ញុំនិងសម្រាប់ជីវិតនៅថ្ងៃបរលោកដែលជាជីវិតពិតប្រាកដ។

25 ដូច្នេះនៅថ្ងៃនោះគ្មាននរណាម្នាក់អាចធ្វើទារុណកម្មដូចទារុណកម្មរបស់ទ្រង់ឡើយ។ពីព្រោះទារុណកម្មអល់ឡោះគឺខ្លាំងក្លាបំផុត។

26 គ្មាននរណាម្នាក់អាចចងពួកកាហ្វៀរជាប់ដូចចំណងរបស់ទ្រង់ឡើយ។បន្ទាប់ពីអល់ឡោះបានរៀបរាប់ពីលទ្ធផលរបស់អ្នកកាហ្វៀរទ្រង់ក៏បានរៀបរាប់ពីលទ្ធផលអ្នកមានជំនឿ។

27 ចំណែកអ្នកមានជំនឿត្រូវបានគេហៅបន្ទាប់ពីស្លាប់និងនៅថ្ងៃបរលោកថា៖ឱព្រលឹងដែលនឹងនរទៅរកជំនឿនិងទង្វើកុសល។

28 ចូរត្រលប់ទៅរកម្ចាស់របស់អ្នកជាមួយនឹងផលបុណ្យដែលទ្រង់បានប្រទានដល់អ្នកនិងការយល់ព្រមពីទ្រង់នូវទង្វើល្អដែលពួកអ្នកបានប្រព្រឹត្ត។

29 ចូរអ្នកចូលក្នុងចំណោមខ្ញុំបម្រើរបស់យើងដែលមានកុសលធម៌។
30 ចូរចូលឋានសួគ៌របស់យើងជាមួយនឹងពួកគេ។ដែលយើងបានរៀបចំវាសម្រាប់
ពួកអ្នក។

## អាល់ហ្ពាទ្បាត់

**គោលបំណងនៃស៊ូរ៉ោះ:** ការរំលឹកពីស្ថានភាពមនុស្សរវាងភាពលំបាកនិងទារុណកម្មរបស់ពួកអ្នកប្រឆាំងនិងការឡើងជណ្តើរពោះម៉ាត់របស់អ្នកមានជំនឿនៅក្នុងថ្ងៃបរលោក។

**តាហ្វសៀរ**

لَآ أُقۡسِمُ بِهَٰذَا ٱلۡبَلَدِ ﴿١﴾ وَأَنتَ حِلُّۢ بِهَٰذَا ٱلۡبَلَدِ ﴿٢﴾ وَوَالِدٖ وَمَا وَلَدَ ﴿٣﴾ لَقَدۡ خَلَقۡنَا ٱلۡإِنسَٰنَ فِي كَبَدٍ ﴿٤﴾
أَيَحۡسَبُ أَن لَّن يَقۡدِرَ عَلَيۡهِ أَحَدٞ ﴿٥﴾ يَقُولُ أَهۡلَكۡتُ مَالٗا لُّبَدًا ﴿٦﴾ أَيَحۡسَبُ أَن لَّمۡ يَرَهُۥٓ أَحَدٌ ﴿٧﴾
أَلَمۡ نَجۡعَل لَّهُۥ عَيۡنَيۡنِ ﴿٨﴾ وَلِسَانٗا وَشَفَتَيۡنِ ﴿٩﴾ وَهَدَيۡنَٰهُ ٱلنَّجۡدَيۡنِ ﴿١٠﴾

1 អល់ឡោះស្បថនឹងប្រទេសហារ៉ម៉វាគឺម៉ាក្កះ។
2 អល់ឡោះបានស្បថនឹងប្រទេសដែលអ្នកកំពុងរស់នៅ។ជាការលើកតម្កើងអ្នកនិង
លើកកម្ពស់អ្នក។ពីព្រោះវត្តមានរបស់អ្នកនៅក្នុងទឹកដីជាកិត្តិយសដ៏ឧត្តុង្គឧត្តម។
3 ហើយអល់ឡោះបានស្បថនឹងឪពុកមនុស្សលោក(អាដាំ)និងកូនចៅរបស់គាត់។
4 ពិតណាស់យើងបានបង្កើតមនុស្សលោកឋិតក្នុងឧបសគ្គជានិច្ចនៅក្នុងលោកីយ៍
នេះរហូតដល់ស្លាប់។
5 តើមនុស្សលោកគិតថាគ្មានអ្នកណាអាចមានអំណាចធ្វើអ្វីលើគេមែនទេនៅពេល
ដែលគេប្រព្រឹត្តអំពើអាក្រក់?គ្មាននរណាអាចបង្ក្រាបពួកគេមែនទេសូម្បីតែម្ចាស់
ដែលបង្កើតពួកគេក៏មិនអាចធ្វើអ្វីគេបានដែរមែនទេ?
6 ដោយគេនិយាយថា៖ខ្ញុំបានចំណាយទ្រព្យសម្បត្តិយ៉ាងច្រើនសន្ធឹកសន្ធាប់។
7 តើគេគិតថាអល់ឡោះមិនបានឃើញការចំណាយដើម្បីអួតខ្លួនពួកគេទេឬ?
ហើយទ្រង់មិនកាត់ក្តីលើទ្រព្យសម្បត្តិគេទេឬ?ថាតើទ្រព្យសម្បត្តិនេះបានមកពី
ណា?ហើយចំណាយទៅលើអ្វី?
8 តើយើងមិនបានបង្កើតគេឱ្យមានភ្នែកមួយគូដើម្បីមើលឃើញទេឬ?
9 ហើយអណ្តាតមួយនិងបបូរមាត់មួយដើម្បីនិយាយទេឬ?
10 តើមិនមែនទេឬយើងបានណែនាំគេឱ្យស្គាល់ផ្លូវល្អនិងអាក្រក់យ៉ាងច្បាស់លាស់?

فَلَا ٱقۡتَحَمَ ٱلۡعَقَبَةَ ﴿١١﴾ وَمَآ أَدۡرَىٰكَ مَا ٱلۡعَقَبَةُ ﴿١٢﴾ فَكُّ رَقَبَةٍ ﴿١٣﴾ أَوۡ إِطۡعَٰمٞ فِي يَوۡمٖ ذِي مَسۡغَبَةٖ ﴿١٤﴾ يَتِيمٗا
ذَا مَقۡرَبَةٍ ﴿١٥﴾ أَوۡ مِسۡكِينٗا ذَا مَتۡرَبَةٖ ﴿١٦﴾ ثُمَّ كَانَ مِنَ ٱلَّذِينَ ءَامَنُواْ وَتَوَاصَوۡاْ بِٱلصَّبۡرِ وَتَوَاصَوۡاْ بِٱلۡمَرۡحَمَةِ
﴿١٧﴾ أُوْلَٰٓئِكَ أَصۡحَٰبُ ٱلۡمَيۡمَنَةِ ﴿١٨﴾ وَٱلَّذِينَ كَفَرُواْ بِـَٔايَٰتِنَا هُمۡ أَصۡحَٰبُ ٱلۡمَشۡـَٔمَةِ ﴿١٩﴾ عَلَيۡهِمۡ نَارٞ مُّؤۡصَدَةُۢ ﴿٢٠﴾

11 តែគេមិនបានដើរនៅលើមាគ៌ាដែលលំបាក(មាគ៌ាទៅកាន់ភាពជោគជ័យ)ឡើយ។
12 តើអ្វីដែលធ្វើឱ្យអ្នក(មូហាំម៉ាត់)ដឹងថាមាគ៌ាដែលលំបាកជាអ្វីនោះ?
13 គឺការដោះលែងខ្ញុំបម្រើដាច់ថ្លៃឱ្យមានសិទ្ធិសេរីភាពប្រុសឬស្រី។
14 ឬផ្តល់ចំណីអាហារនៅថ្ងៃដែលមានគ្រោះទុរភិក្ស ហើយគ្មានចំណីអាហារ។
15 ផ្តល់ចំណីអាហារដល់កូនកំព្រាដែលជាញាតិសន្តាន។
16 ឬអ្នកក្រីក្រដែលគ្មានអ្វីសោះ។
17 បន្ទាប់មកគេបានក្លាយជាមនុស្សម្នាក់ក្នុងចំណោមអ្នកដែលមានជំនឿចំពោះអល់
ឡោះនឹងបានផ្តែផ្តាំគ្នាឱ្យមានការអត់ធ្មត់ហើយនិងបានផ្តែផ្តាំគ្នាឱ្យមានក្តីមេត្តាករុណា។




18 ពួកគេនោះហើយគឺជាពួកអ្នកដែលទទួលបញ្ជីកំណត់ត្រាដោយដៃស្ដាំ។
19 ហើយពួកដែលគ្មានជំនឿនឹងអាយ៉ាត់ៗរបស់យើងដែលបានបញ្ចុះមកឱ្យអ្នកនាំ
សារពួកគេគឺជាពួកដែលទទួលបញ្ជីដោយដៃឆ្វេង។
20 ភ្លើងនរកគ្របដណ្ដប់លើពួកគេយ៉ាងជិត។

## អាស្សាំ

**គោលបំណងនៃស៊ូរោះ**ផ្ដោតលើការបង្ហាញពីអាយ៉ាត់ៗរបស់អល់ឡោះនិងនៀកម៉ាត់របស់ទ្រង់ដែលសុសសាយគ្រប់ទីកន្លែងគ្រប់ជីវិតនិងគ្រប់ស្ថានភាព។ដើម្បីលាងជម្រះជីវិតនិងបោះបង់ចោលអំពើអាក្រក់។

**តាហ្សៀរ**

وَٱلشَّمۡسِ وَضُحَىٰهَا ١ وَٱلۡقَمَرِ إِذَا تَلَىٰهَا ٢ وَٱلنَّهَارِ إِذَا جَلَّىٰهَا ٣ وَٱلَّيۡلِ إِذَا يَغۡشَىٰهَا ٤
وَٱلسَّمَآءِ وَمَا بَنَىٰهَا ٥ وَٱلۡأَرۡضِ وَمَا طَحَىٰهَا ٦ وَنَفۡسٖ وَمَا سَوَّىٰهَا ٧
فَأَلۡهَمَهَا فُجُورَهَا وَتَقۡوَىٰهَا ٨ قَدۡ أَفۡلَحَ مَن زَكَّىٰهَا ٩ وَقَدۡ خَابَ مَن دَسَّىٰهَا ١٠

1 អល់ឡោះស្បថនឹងព្រះអាទិត្យហើយនិងស្បថនឹងពេលដែលរស្មីដ៏ត្រចះត្រចង់
របស់វារះឡើងពីទិសខាងកើត។
2 ហើយទ្រង់ស្បថនឹងព្រះច័ន្ទនៅពេលដែលវាបានរះឡើងបន្ទាប់ពីព្រះអាទិត្យលិច ។
3 ហើយទ្រង់ស្បថនឹងពេលថ្ងៃនៅពេលដែលព្រះអាទិត្យបានបញ្ចេញពន្លឺពាស
ពេញផែនដី។
4 ហើយទ្រង់ស្បថនឹងពេលយប់នៅពេលដែលវាបានគ្របដណ្ដប់ពាសពេញផែនដី
ដែលធ្វើឱ្យងងឹតស្ងួនស្ងៀ។
5 ហើយទ្រង់ស្បថនឹងមេឃនិងអ្នកដែលបានបង្កើតវា។
6 ហើយទ្រង់ស្បថនឹងផែនដីនិងអ្នកដែលបានលាតសន្ធឹងវា។
7 ហើយទ្រង់ស្បថនឹងជីវិតនិងអ្នកដែលបានធ្វើឱ្យគេមានលក្ខណៈសមរម្យ។
8 ហើយទ្រង់បានចង្អុលបង្ហាញដល់គេឱ្យស្គាល់នូវអំពើអាក្រក់ដែលត្រូវជៀសវាង
និងអំពើល្អដែលត្រូវអនុវត្តន៍។
9 ពិតណាស់ជោគជ័យហើយសម្រាប់អ្នកដែលសម្អាតខ្លួនរបស់គេដោយសាងនូវ
អំពើល្អនិងជៀសវាងពីប្រការអាក្រក់។
10 ហើយប្រាកដណាស់បរាជ័យហើយសម្រាប់អ្នកដែលជាន់ឈ្លីខ្លួនឯងដោយ
ប្រព្រឹត្តអំពើបាបចំពោះអល់ឡោះ។

**បន្ទាប់ពីអល់ឡោះបានរំលឹកពីការបរាជ័យរបស់អ្នកដែលជាន់ឈ្លីខ្លួនឯងដោយប្រព្រឹត្តអំពើបាបនោះទ្រង់ក៏បានលើកយកក្រុមសាមូទមកធ្វើជាឧទាហរណ៍។**

كَذَّبَتۡ ثَمُودُ بِطَغۡوَىٰهَآ ١١ إِذِ ٱنۢبَعَثَ أَشۡقَىٰهَا ١٢ فَقَالَ لَهُمۡ رَسُولُ ٱللَّهِ نَاقَةَ ٱللَّهِ وَسُقۡيَٰهَا ١٣
فَكَذَّبُوهُ فَعَقَرُوهَا فَدَمۡدَمَ عَلَيۡهِمۡ رَبُّهُم بِذَنۢبِهِمۡ فَسَوَّىٰهَا ١٤ وَلَا يَخَافُ عُقۡبَٰهَا ١٥

11 ក្រុមសាមូដបានបដិសេធនឹងអ្នកនាំសាររបស់ពួកគេណាពីស្ទទ្រះដោយសារការ
បំពានហួសព្រំដែនរបស់ពួកគេដោយប្រព្រឹត្តអំពើអាបាយមុខនិងអំពើបាប។
12 នៅពេលដែលជនកំណាចបំផុតក្នុងចំណោមពួកគេបានចេញមកសម្លាប់សត្វអូដ្ឋញី។
13 ណាពីស្ទទ្រះបាននិយាយទៅកាន់ពួកគេថា៖ចូរដោះលែងសត្វអូដ្ឋរបស់អល់
ឡោះនិងហើយកុំរារាំងដល់ការផឹករបស់វាឱ្យសោះ។
14 តែពួកគេបានបដិសេធនឹងអ្នកនាំសាររបស់ពួកគេនិងបានសម្លាប់វា។អល់ឡោះ



ក៏បានបំផ្លាញពួកគេ និងដាក់ទារុណកម្មលើពួកគេ។ពេលនោះម្ចាស់របស់ពួកគេបាន
បំផ្លាញពួកគេដោយសម្រេចយ៉ាងខ្លាំងបាន្ទចក៏យកជីវិតពួកគេដោយសារតែបាបកម្ម
របស់ពួកគេ។ហើយទ្រង់បានធ្វើឱ្យពួកគេវិនាសអន្តរាយទាំងអស់គ្នា។
15 អល់ឡោះបានធ្វើចំពោះពួកគេបែបនោះគឺទ្រង់មិនខ្លាចពីលទ្ធផលចុងក្រោយ
របស់ពួកគេនោះទេ។

## អាល់ឡៃល៍

**គោលបំណងនៃស៊ូរោះ**បញ្ជាក់ពីភាពខុសគ្នារវាងអាយ៉ាត់ៗនិងជីវិតនិងទង្វើរ។ដើម្បី
បង្ហាញពីភាពខុសគ្នារវាងអ្នកមានជំនឿនិងអ្នកគ្មានជំនឿ។

**តាហ្វសៀរ**

وَٱلَّيۡلِ إِذَا يَغۡشَىٰ ﴿١﴾ وَٱلنَّهَارِ إِذَا تَجَلَّىٰ ﴿٢﴾ وَمَا خَلَقَ ٱلذَّكَرَ وَٱلۡأُنثَىٰٓ ﴿٣﴾ إِنَّ سَعۡيَكُمۡ لَشَتَّىٰ ﴿٤﴾
فَأَمَّا مَنۡ أَعۡطَىٰ وَٱتَّقَىٰ ﴿٥﴾ وَصَدَّقَ بِٱلۡحُسۡنَىٰ ﴿٦﴾ فَسَنُيَسِّرُهُۥ لِلۡيُسۡرَىٰ ﴿٧﴾ وَأَمَّا مَنۢ بَخِلَ وَٱسۡتَغۡنَىٰ ﴿٨﴾
وَكَذَّبَ بِٱلۡحُسۡنَىٰ ﴿٩﴾ فَسَنُيَسِّرُهُۥ لِلۡعُسۡرَىٰ ﴿١٠﴾ وَمَا يُغۡنِي عَنۡهُ مَالُهُۥٓ إِذَا تَرَدَّىٰٓ ﴿١١﴾

1 អល់ឡោះស្បថនឹងពេលយប់នៅពេលដែលមេឃនិងដីគ្របដណ្តប់ដោយភាពង
ងឹត។
2 ហើយទ្រង់ស្បថនឹងពេលថ្ងៃពេលដែលវាបានបញ្ចេញពន្លឺដ៏ត្រចះត្រចង់។
3 ហើយទ្រង់ស្បថនឹងអ្វីដែលទ្រង់បានបង្កើតឱ្យមានពីរភេទ៖ប្រុសនិងស្រី។
4 ពិតណាស់ទង្វើរបស់ពួកអ្នកខុសៗគ្នា។អ្នកខ្លះធ្វើទង្វើល្អដែលជាមូលហេតុចូល
ឋានសួគ៌។អ្នកខ្លះទៀតធ្វើទង្វើអាក្រក់ដែលជាមូលហេតុចូលឋាននរក។
5 ឯអ្នកដែលបានបរិច្ចាគទ្រព្យរបស់គេក្នុងផ្លូវល្អ និងកោតខ្លាចអល់ឡោះដោយ
ជៀសវាងពីប្រការដែលទ្រង់បានហាមឃាត់។
6 មានជំនឿជឿជាក់ចំពោះការសន្យារបស់អល់ឡោះដែលនឹងតបស្នងប្រការល្អ
វិញនោះ។
7 យើងនឹងសម្រួលឱ្យគេនូវការប្រព្រឹត្តិទង្វើល្អហើនិងបរិច្ចាគក្នុងផ្លូវអល់ឡោះ។
8 រីឯអ្នកណាហើយដែលកំណាញ់មិនព្រមព្យាយាមបរិច្ចាគទ្រព្យនឹងមិនត្រូវការ
ជំនួយពីអល់ឡោះ។
9 ហើយបដិសេធចំពោះការសន្យារបស់អល់ឡោះដែលនឹងតបស្នងប្រការល្អវិញនោះ។
10 យើងនឹងសម្រួលឱ្យគេនូវការប្រព្រឹត្តិទង្វើអាក្រក់និងផ្តលភាពលំបាកក្នុងការ
ប្រព្រឹត្តអំពើល្អ។
11 ទ្រព្យសម្បត្តិដែលគេរិះកំណាញ់មិនផ្តល់ប្រយោជន៍ដល់គេឡើយ។នៅពេលគេ
វិនាសនិងធ្លាក់ចូលទៅក្នុងឋាននរក។

إِنَّ عَلَيۡنَا لَلۡهُدَىٰ ﴿١٢﴾ وَإِنَّ لَنَا لَلۡأٓخِرَةَ وَٱلۡأُولَىٰ ﴿١٣﴾ فَأَنذَرۡتُكُمۡ نَارٗا تَلَظَّىٰ ﴿١٤﴾
لَا يَصۡلَىٰهَآ إِلَّا ٱلۡأَشۡقَى ﴿١٥﴾ ٱلَّذِي كَذَّبَ وَتَوَلَّىٰ ﴿١٦﴾ وَسَيُجَنَّبُهَا ٱلۡأَتۡقَى ﴿١٧﴾ ٱلَّذِي يُؤۡتِي مَالَهُۥ يَتَزَكَّىٰ ﴿١٨﴾
وَمَا لِأَحَدٍ عِندَهُۥ مِن نِّعۡمَةٖ تُجۡزَىٰٓ ﴿١٩﴾ إِلَّا ٱبۡتِغَآءَ وَجۡهِ رَبِّهِ ٱلۡأَعۡلَىٰ ﴿٢٠﴾ وَلَسَوۡفَ يَرۡضَىٰ ﴿٢١﴾

12 យើងមានតួនាទីចង្អុលបង្ហាញផ្លូវល្អត្រឹមត្រូវ និងផ្លូវវង្វេង។
13 ពិតណាស់សម្រាប់យើងគឺអ្វីដែលនៅក្នុងថ្ងៃបរលោកនិងអ្វីដែលនៅក្នុងលោកី
យ៍។យើងចាត់ចែងវាតាមអ្វីដែលយើងចង់។
14 យើងបានដាស់តឿនពួកអ្នកឱ្យប្រុងប្រយ័ត្នចំពោះភ្លើងនរកដែលកំពុងឆាបឆេះ





យ៉ាងសន្ធោសន្ធៅប្រសិនបើពួកអ្នកជាអ្នកប្រឆាំងនឹងអល់ឡោះ។
15 គ្មាននរណាស្គាល់រសជាតិកម្តៅរបស់ភ្លើងនរកទេលើកលែងតែពួកកើហ្វៀរ។
16 អ្នកដែលបដិសេធមិនព្រមជឿចំពោះការពិតដែលរ៉សូលបាននាំមក។ហើយងាក
ចេញពីការគោរពប្រតិបត្តិតាមបទបញ្ជារបស់អល់ឡោះ។
17 ហើយគេនឹងបញ្ចៀសអ្នកដែលកោតខ្លាចអល់ឡោះយ៉ាងខ្លាំងក្លាអំពីវានរកគឺអា
ពូតើកើរ។
18 អ្នកដែលបរិច្ចាគទ្រព្យសម្បត្តិរបស់គេក្នុងផ្លូវល្អដើម្បីសម្អាត់ខ្លួនរបស់គេពីបាបកម្ម។
19 គេមិនមែនបរិច្ចាគដើម្បីសងគុណនរណាម្នាក់ ដែលធ្វើល្អចំពោះគេនោះទេ។
20 លើកលែងតែដើម្បីស្វែងរកការយល់ព្រមពីម្ចាស់របស់គេដ៏មហាឧត្តុង្គឧត្តមប៉ុណ្ណោះ។
21 ហើយគេពិតជានឹងពេញចិត្តនូវអ្វីដែលអល់ឡោះ តបស្នងដល់គេ។

## អាត់ទូហា

**គោលបំណងនៃស៊ូរ៉ោះ:** រៀបរាប់ពីការថែរក្សារបស់អល់ឡោះចំពោះអ្នកនាំសាររបស់ទ្រង់និងផ្តល់ដល់គាត់នូវនៀកម៉ាត់វ៉ាហ៊ីដែលមានជាប់និងគាត់ជានិច្ចជាក្តីមេត្តាសម្រាប់គាត់និងជាការរំលឹងសម្រាប់អ្នកមានជំនឿឱ្យចេះថ្លែងអំណរគុណ។

**តាហ្សៀរ**

وَٱلضُّحَىٰ ١ وَٱلَّيۡلِ إِذَا سَجَىٰ ٢ مَا وَدَّعَكَ رَبُّكَ وَمَا قَلَىٰ ٣
وَلَلۡأٓخِرَةُ خَيۡرٞ لَّكَ مِنَ ٱلۡأُولَىٰ ٤ وَلَسَوۡفَ يُعۡطِيكَ رَبُّكَ فَتَرۡضَىٰٓ ٥
أَلَمۡ يَجِدۡكَ يَتِيمٗا فَـَٔاوَىٰ ٦ وَوَجَدَكَ ضَآلّٗا فَهَدَىٰ ٧ وَوَجَدَكَ عَآئِلٗا فَأَغۡنَىٰ ٨
فَأَمَّا ٱلۡيَتِيمَ فَلَا تَقۡهَرۡ ٩ وَأَمَّا ٱلسَّآئِلَ فَلَا تَنۡهَرۡ ١٠ وَأَمَّا بِنِعۡمَةِ رَبِّكَ فَحَدِّثۡ ١١

1 អល់ឡោះស្បថនឹងពេលដំបូងនៃថ្ងៃ។
2 ហើយទ្រង់ស្បថនឹងពេលយប់នៅពេលដែលវាងងឹតហើយមនុស្សស្រម្រាក់ពីកិច្ចការ។
3 ម្ចាស់របស់អ្នក( ឱមូហាំម៉ាត់ )មិនបានខឹងអ្នកដូចដែលពួកមូស្ហរីគីននិយាយ
ឡើយខណៈពេលដែលបាត់វ៉ាហ៊ីមួយរយៈ។
4 ជាការពិតណាស់ថ្ងៃបរលោកប្រសើរសម្រាប់អ្នកជាងលោកិយនេះទៅទៀត។
ដោយមានក្នុងវាគឺលាភសក្ការៈដែលគ្មានថ្ងៃដាច់ឡើយ។
5 ហើយគេពិតជានឹងប្រទាននៀកម៉ាត់ឱ្យអ្នកនិងប្រជាជាតិរបស់អ្នក។ហើយពួក
អ្នកប្រាកដជានឹងពេញចិត្តជាមិនខាន។
6 ពិតណាស់ទ្រង់បានឃើញអ្នកជាក្មេងកំព្រាបន្ទាប់ពីឪពុកអ្នកស្លាប់និងហើយ
ទ្រង់បានធ្វើឱ្យអ្នកមានទីជម្រកសម្រាប់ជ្រកកោនដោយបានរស់នៅជាមួយជីតារបស់
អ្នកអាប់ឌុលមូត្តលីបនិងឪពុកមាអ្នកអាពូតលីប។
7 ហើយអ្នកមិនទាន់យល់ដឹងអំពីគួរអាននិងគោលជំនឿបន្ទាប់មកទ្រង់ក៏ចង្អុល
បង្ហាញឱ្យអ្នកបានដឹង។
8 ទ្រង់បានឃើញអ្នកមានជីវភាពក្រីក្របន្ទាប់មកទ្រង់ធ្វើឱ្យអ្នកមានជីវភាពធូរធារ។
9 ចូរកុំធ្វើបាបនិងកុំកៀបសង្កត់កូនកំព្រាដោយសារគេទន់ខ្សោយ។
10 ហើយចូរអ្នកកុំគំហកចំពោះអ្នកសុំទានឱ្យសោះ។
11 ចូរថ្លែងអំណរគុណចំពោះនៀកម៉ាត់ដែលអល់ឡោះបានប្រទានឱ្យនិងចូរអ្នក
រៀបរាប់អំពីវា។



## អាស្ហស្ហើរហ៍

**គោលបំណងនៃស៊ូរោះ**

ការរៀបរាប់ពីការថែរក្សាយ៉ាងពេញលេញរបស់អល់ឡោះចំពោះអ្នកនាំសាររបស់ទ្រង់ដោយបញ្ចៀសពីគាត់នូវទុក្ខព្រួយឧបសគ្គនិងក្តីលំបាកផ្សេងៗ។

**តាហ្វសៀរ**

أَلَمْ نَشْرَحْ لَكَ صَدْرَكَ ﴿١﴾ وَوَضَعْنَا عَنكَ وِزْرَكَ ﴿٢﴾ الَّذِي أَنقَضَ ظَهْرَكَ ﴿٣﴾ وَرَفَعْنَا لَكَ
ذِكْرَكَ ﴿٤﴾ فَإِنَّ مَعَ الْعُسْرِ يُسْرًا ﴿٥﴾ إِنَّ مَعَ الْعُسْرِ يُسْرًا ﴿٦﴾ فَإِذَا فَرَغْتَ فَانصَبْ ﴿٧﴾ وَإِلَىٰ رَبِّكَ فَارْغَب ﴿٨﴾

1 ពិតណាស់យើងបានបើកចិត្តរបស់អ្នកឱ្យពេញចិត្តនឹងការទទួលយកវាហើយ។
2 ហើយយើងបានដាក់ចុះនូវបន្ទុកធ្ងន់ៗរបស់អ្នក។
3 ដែលបានផ្ទុកយ៉ាងធ្ងន់ស្ទើរតែបំបាក់ខ្នងរបស់អ្នក។
4 ហើយយើងបានលើកកិត្តិនាមរបស់អ្នកឱ្យខ្ពង់ខ្ពស់រហូតដល់មានការរំលឹកក្នុងពេលអាហ្សាននិងពេលកោះម៉ាត់និងផ្សេងពីនេះទៀត។
5 ពិតប្រាកដណាស់ជាមួយនឹងសេចក្តីលំបាកវេទនាគឺនឹងមានភាពងាយស្រួល។
6 ហើយពិតប្រាកដណាស់ជាមួយនឹងសេចក្តីលំបាកវេទនាគឺនឹងមានភាពងាយស្រួល។ប្រសិនបើអ្នកមានជំនឿបែបនេះគឺគ្មានបញ្ហាទេសម្រាប់ការធ្វើបាប់ពីក្រុមរបស់អ្នកហើយក៏គ្មានអ្វីរារាំងក្នុងការអំពាវនាវទៅរកអល់ឡោះដែរ។
7 នៅពេលដែលអ្នកបានបំពេញភារកិច្ចរួចរាល់ហើយចូរអ្នកខិតខំគោរពសក្ការៈចំពោះម្ចាស់របស់អ្នក។
8 ហើយចូរអ្នកប៉ងប្រាថ្នានិងសង្ឃឹមទៅចំពោះម្ចាស់របស់អ្នកតែមួយគត់។

## អាត់ទីន

**គោលបំណងនៃស៊ូរោះ**

ការរៀបរាប់ពីតម្លៃរបស់មនុស្សនិងភាពថ្លៃថ្នូររបស់គេដោយសាសនារបស់គេនិងសេចក្តីថោកទាបដោយសារបោះបង់ចោលវាព្រមទាំងការស្បថនឹងបណ្តាទីកន្លែងបញ្ចុះវាហើយ។

**តាហ្វសៀរ**

وَالتِّينِ وَالزَّيْتُونِ ﴿١﴾ وَطُورِ سِينِينَ ﴿٢﴾ وَهَٰذَا الْبَلَدِ الْأَمِينِ ﴿٣﴾ لَقَدْ خَلَقْنَا الْإِنسَانَ فِي أَحْسَنِ تَقْوِيمٍ ﴿٤﴾
ثُمَّ رَدَدْنَاهُ أَسْفَلَ سَافِلِينَ ﴿٥﴾ إِلَّا الَّذِينَ آمَنُوا وَعَمِلُوا الصَّالِحَاتِ فَلَهُمْ أَجْرٌ غَيْرُ مَمْنُونٍ ﴿٦﴾
فَمَا يُكَذِّبُكَ بَعْدُ بِالدِّينِ ﴿٧﴾ أَلَيْسَ اللَّهُ بِأَحْكَمِ الْحَاكِمِينَ ﴿٨﴾

1 អល់ឡោះបានស្បថនឹងផ្លែល្វានិងកន្លែងដាំដុះវាហើយទ្រង់ស្បថនឹងផ្លែអូលីវនិងកន្លែងដាំដុះវាដែលស្ថិតនៅទឹកដីបាឡេស្ទីនដែលជាកន្លែងដែលគេបានតែងតាំងណាពីអ៊ីសា។
2 ហើយទ្រង់ស្បថនឹងភ្នំទួរស៊ីណាកដាកន្លែងដែលអល់ឡោះបាននិយាយទៅកាន់មូសា។
3 ហើយទ្រង់ស្បថនឹងទឹកដីម៉ាក្កះជាកន្លែងផ្តល់សុន្តិភាពសម្រាប់អ្នកដែលចូលក្នុងវាហើយជាកន្លែងដែលគេតែងតាំងណាពីមូហាំម៉ាត់។
4 ជាការពិតណាស់យើងបានបង្កើតមនុស្សលោកស្ថិតក្នុងទ្រង់ទ្រាយមួយសមសួននិងល្អប្រសើរបំផុត។
5 បន្ទាប់មកយើងឱ្យគេត្រលប់ទៅកាន់ភាពចាស់ជរាទ្រុឌទ្រោមនៅលើលោកិយ៍ដោយខ្លួនប្រាណរបស់ពួកគេមិនអាចជួយអ្វីបានឡើយហើយបន្ទាប់មកយើងបាន





បញ្ជូនពួកគេត្រឡប់ទៅកាន់កន្លែង ដែលទាបជាងគេបំផុតគឺឋានរក។
(6) លើកលែងតែពួកអ្នកមានជំនឿចំពោះអល់ឡោះនិងប្រតិបត្តិអំពើល្អហើយពួកគេនូវតែទទួលបានផលបុណ្យជានិច្ចបើទោះជាពួកគេចាស់ជរាក្តោយវាគឺឋានសួគ៌។
(7) តើអ្វីដែលធ្វើឱ្យអ្នក(មនុស្សលោក)បដិសេធនឹងថ្ងៃជំនុំជំរះបន្ទាប់ពីមានភស្តុតាងជាច្រើនបញ្ជាក់នោះ?
(8) តើមិនមែនទេឬដែលអល់ឡោះចាត់ទុកថ្ងៃបរលោកជាថ្ងៃកាត់ក្តីហើយទ្រង់ជាអ្នកកាត់សេចក្តីដ៏សុក្រឹតបំផុតនិងយុត្តិធម៌បំផុតជាងអ្នកកាត់សេចក្តីទាំងឡាយ?តើទៅរួចដែរឬដែលអល់ឡោះទុកចោលខ្ញុំរបស់ទ្រង់ដោយមិនកាត់ក្តីរវាងពួកគេដោយអ្នកសាងល្អនឹងទទួលផលល្អហើយអ្នកសាងអាក្រក់នឹងទទួលផលអាក្រក់នោះ?

## អាល់អាឡាក់

**គោលបំណងនៃស៊ូរ៉ោះ:** បញ្ជាក់ពីភាពពេញលេញនៃមនុស្សដោយចំណេះដឹងនិងការផ្តល់វាហ៊ីដែលវាជាទំនាក់ទំនងរវាងខ្ញុំបំរើនឹងម្ចាស់របស់គេនិងការអោនលំទោនទៅចំពោះទ្រង់ហើយភាពខ្វះខាតរបស់គេដោយប្រព្រឹត្តផ្ទុយពីនោះ។

**តាហ្វសៀរ**

ٱقۡرَأۡ بِٱسۡمِ رَبِّكَ ٱلَّذِي خَلَقَ ١ خَلَقَ ٱلۡإِنسَٰنَ مِنۡ عَلَقٍ ٢ ٱقۡرَأۡ وَرَبُّكَ ٱلۡأَكۡرَمُ ٣
ٱلَّذِي عَلَّمَ بِٱلۡقَلَمِ ٤ عَلَّمَ ٱلۡإِنسَٰنَ مَا لَمۡ يَعۡلَمۡ ٥

(1) ចូរអ្នក(មូហាំម៉ាត់)សូត្រនូវអ្វីដែលអល់ឡោះបានផ្តល់វ៉ាហ៊ីដល់អ្នកដោយផ្តើមពីនាមម្ចាស់របស់អ្នកដែលបានបង្កើតនូវអ្វីៗទាំងអស់ចុះ។
(2) គេបង្កើតមនុស្សផ្តើមពីទឹកកាមបន្ទាប់មកវាក្លាយជាដុំឈាមកកមួយដុំ។
(3) ចូរអ្នក(មូហាំម៉ាត់)សូត្រចុះនូវអ្វីដែលអល់ឡោះបានផ្តល់វ៉ាហ៊ីដល់អ្នកហើយម្ចាស់របស់អ្នកមហាសប្បុរស។
(4) ដែលទ្រង់បានបង្រៀនឱ្យមនុស្សចេះដោយសរសេរដោយប្រើប៊ិក។
(5) ទ្រង់បង្រៀនមនុស្សឱ្យចេះដឹងនូវអ្វីដែលគេមិនបានដឹង។

كَلَّآ إِنَّ ٱلۡإِنسَٰنَ لَيَطۡغَىٰٓ ٦ أَن رَّءَاهُ ٱسۡتَغۡنَىٰٓ ٧ إِنَّ إِلَىٰ رَبِّكَ ٱلرُّجۡعَىٰٓ ٨ أَرَءَيۡتَ ٱلَّذِي
يَنۡهَىٰ ٩ عَبۡدًا إِذَا صَلَّىٰٓ ١٠ أَرَءَيۡتَ إِن كَانَ عَلَى ٱلۡهُدَىٰٓ ١١ أَوۡ أَمَرَ بِٱلتَّقۡوَىٰٓ ١٢ أَرَءَيۡتَ إِن كَذَّبَ
وَتَوَلَّىٰٓ ١٣ أَلَمۡ يَعۡلَم بِأَنَّ ٱللَّهَ يَرَىٰ ١٤ كَلَّا لَئِن لَّمۡ يَنتَهِ لَنَسۡفَعَۢا بِٱلنَّاصِيَةِ ١٥ نَاصِيَةٖ كَٰذِبَةٍ خَاطِئَةٖ ١٦
فَلۡيَدۡعُ نَادِيَهُۥ ١٧ سَنَدۡعُ ٱلزَّبَانِيَةَ ١٨ كَلَّا لَا تُطِعۡهُ وَٱسۡجُدۡ وَٱقۡتَرِب ١٩

(6) ការពិតមនុស្សលោកគឺពិតជាបំពានដូចជាអាពូជើហ៊ីលដែលបានបំពានលើច្បាប់របស់អល់ឡោះ។
(7) ដោយសារគេយល់ឃើញថាខ្លួនគេមានគ្រប់គ្រាន់ហើយនូវអ្វីដែលពួកគេមានអំពីទ្រព្យសម្បត្តិនិងអំណាច។
(8) ពិតប្រាកដណាស់ម្ចាស់របស់អ្នកតែមួយគត់ដែលជាកន្លែងវិលត្រឡប់នៅថ្ងៃបរលោកហើយគេនឹងតបស្នងរាល់អ្វីសាកសមសម្រាប់ពួកគេ។
(9) តើអ្នកឃើញទេនូវការហាមឃាត់របស់អាពូជើហ៊ីល?
(10) ខ្ញុំរបស់អល់ឡោះ(មូហាំម៉ាត់)នៅពេលដែលគេសឡាតនៅឯកាក់ហ្ពះទេឬ?
(11) តើអ្នកយល់ឃើញយ៉ាងដូចម្តេចប្រសិនបើអ្នកដែលត្រូវបានគេហាមឃាត់ស្ថិតនៅលើមាគ៌ាដ៏ត្រឹមត្រូវនិងការចង្អុលបង្ហាញពីម្ចាស់របស់គេ។
(12) ឬគេប្រើមនុស្សឱ្យកោតខ្លាចអល់ឡោះដោយអនុវត្តន៍តាមបទបញ្ជាទ្រង់នឹង

ជៀសវាងប្រការដែលទ្រង់ហាមឃាត់។
13 តើអ្នកយល់ឃើញយ៉ាងដូចម្ដេចដែរប្រសិនបើគេបានបដិសេធនឹងអ្វីដែលអ្នកនាំសារបាននាំមកនិងបែរចេញពីវាតើគេមិនខ្លាចអល់ឡោះទេឬ?
14 តើគេមិនដឹងទេឬថាអល់ឡោះពិតជាឃើញទង្វើរបស់គេនោះ ?គ្មានអ្វីអាចលាក់បាំងនឹងទ្រង់បានឡើយ។
15 វាមិនដូចអ្វីដែលអ្នកគិតទេ!ផ្ទុយទៅវិញ !ប្រសិនបើគេមិនឈប់បំពានលើខ្ញុំបំរើយើងទេនោះយើងនឹងចាប់ក្បាលរបស់គេរុញទម្លាក់ទៅក្នុងនរកជាមិនខាន ។
16 ម្ចាស់ក្បាលដែលនិយាយភូតកុហកនិងប្រព្រឹត្តអំពើបាប។
17 ដូច្នេះចូរទុកឱ្យអ្នកដែលគេចាប់ក្បាលរបស់គេទម្លាក់ចូលក្នុងនរកស្រែកហៅក្រុមរបស់គេមកជួយចុះ។
18 យើងនឹងហៅពួកម៉ាឡាអ៊ីកាត់ដែលសាហាវឃោរឃៅពួកគេមិនប្រឆាំងនិងបញ្ជាអល់ឡោះឡើយហើយធ្វើតាមអ្វីដែលទ្រង់បញ្ជា។ពួកគេនឹងចាប់វាទម្លាក់ទៅក្នុងភ្លើងនរក។
19 វាមិនដូចអ្វីដែលអ្នកគិតទេ!ផ្ទុយទៅវិញចូរអ្នកកុំធ្វើតាមគេឱ្យសោះហើយចូរអ្នកស៊ូជូតនិងបញ្ចិតខ្លួនទៅចំពោះទ្រង់ដោយការប្រតិបត្តិនិងការគោរពសក្ការៈចំពោះទ្រង់។

## អាល់កដរ៍

**គោលបំណងនៃស៊ូរ៉ោះ**

បញ្ជាក់ពីភាពអស្ចារ្យនិងគុណតម្លៃនៃយប់ឡៃឡាទុលកដរ៍ព្រមទាំងអ្វីដែលបញ្ចុះក្នុងវា។

**តាហ្វសៀរ**

إِنَّآ أَنزَلۡنَٰهُ فِي لَيۡلَةِ ٱلۡقَدۡرِ ١ وَمَآ أَدۡرَىٰكَ مَا لَيۡلَةُ ٱلۡقَدۡرِ ٢ لَيۡلَةُ ٱلۡقَدۡرِ خَيۡرٞ مِّنۡ أَلۡفِ شَهۡرٖ ٣
تَنَزَّلُ ٱلۡمَلَٰٓئِكَةُ وَٱلرُّوحُ فِيهَا بِإِذۡنِ رَبِّهِم مِّن كُلِّ أَمۡرٖ ٤ سَلَٰمٌ هِيَ حَتَّىٰ مَطۡلَعِ ٱلۡفَجۡرِ ٥

1 ពិតណាស់យើងបានបញ្ចុះគម្ពីរគួរអានមួយទាំងមូលមកកាន់មេឃលោកីយ៍ដូចដែរយើងបានបញ្ចុះវាមកឱ្យណាពីមូហាំម៉ាត់នៅក្នុងយប់ឡៃឡាតុលកដរ៍ក្នុងខែរ៉ម៉ាឌន។
2 ហើយតើអ្នក( មូហាំម៉ាត់ )ដឹងទេថាតើយប់យប់ឡៃឡាទុលកដរ៍ល្អអស្ចារ្យប៉ុណ្ណានោះ ?
3 នេះជាយប់ដ៏ល្អអស្ចារ្យហើយអំពើល្អនៅក្នុងយប់នោះគឺមួយយប់ល្អជាងមួយពាន់ខែសម្រាប់អ្នកដែលបញ្ជូវាដោយមានជំនឿនិងសង្ឃឹមទទួលបានផលបុណ្យ។
4 ម៉ាឡាអ៊ីកាត់ជាច្រើននិងជីព្រីលចុះមកក្នុងយប់នោះដោយមានការអនុញ្ញាតពីម្ចាស់របស់ពួកគេ ដើម្បីអនុវត្តរាល់បទបញ្ជារបស់អល់ឡោះនៅក្នុងឆ្នាំនោះអំពីរីស្គីឬការស្លាប់ឬការចាប់កំណើតឬអ្វីផ្សេងទៀតនូវអ្វីដែលអល់ឡោះបានកំណត់។
5 ហើយនៅក្នុងយប់នោះពោរពេញដោយសេចក្ដីសុខសន្តិភាពរហូតដល់ពេលអារុណរះ។

## អាល់ហ្ពៃយីណះ

**គោលបំណងនៃស៊ូរ៉ោះ** ការរៀបរាប់ពីឋានៈនៃសាររបស់ណាពីនិងភាពច្បាស់លាស់របស់វានិងអ្វីដែលបញ្ចុះក្នុងវា។

**តាហ្វសៀរ**

لَمۡ يَكُنِ ٱلَّذِينَ كَفَرُواْ مِنۡ أَهۡلِ ٱلۡكِتَٰبِ وَٱلۡمُشۡرِكِينَ مُنفَكِّينَ حَتَّىٰ تَأۡتِيَهُمُ ٱلۡبَيِّنَةُ ١ رَسُولٞ مِّنَ ٱللَّهِ
يَتۡلُواْ صُحُفٗا مُّطَهَّرَةٗ ٢ فِيهَا كُتُبٞ قَيِّمَةٞ ٣ وَمَا تَفَرَّقَ ٱلَّذِينَ أُوتُواْ ٱلۡكِتَٰبَ إِلَّا مِنۢ بَعۡدِ مَا جَآءَتۡهُمُ





ٱلْبَيِّنَةُ ﴿٤﴾ وَمَآ أُمِرُوٓا۟ إِلَّا لِيَعْبُدُوا۟ ٱللَّهَ مُخْلِصِينَ لَهُ ٱلدِّينَ حُنَفَآءَ وَيُقِيمُوا۟ ٱلصَّلَوٰةَ وَيُؤْتُوا۟
ٱلزَّكَوٰةَ ۚ وَذَٰلِكَ دِينُ ٱلْقَيِّمَةِ ﴿٥﴾

1 ពួកដែលគ្មានជំនឿនៃពួកជ្វីហ្វនិងពួកគ្រឹស្ទាននិងពួកមូស្ហរីគីនមិនបោះបង់ភាពគ្មានជំនឿនិងប្រការស្ហ៊ីរិកជាដាច់ខាត។រហូតទាល់តែភស្តុតាងយ៉ាងច្បាស់លាស់បានមកដល់។

2 ភស្តុតាងយ៉ាងច្បាស់លាស់នោះគឺអ្នកនាំសារម្នាក់ដែលបានតែងតាំងមកពីអល់ឡោះនិងសូត្រគម្ពីរដ៏ស្អាតស្អំមិនត្រូវប៉ះពាល់វាឡើយលើកលែងតែអ្នកជ្រះស្អាត។

3 នៅក្នុងគម្ពីរនោះគឺមានដំណឹងពិតនិងច្បាប់ដ៏យុត្តិធម៌ដែលនាំមនុស្សទៅរកមាគ៌ាដ៏ត្រឹមត្រូវនិងការចង្អុលបង្ហាញ។

4 ពិតណាស់ការខ្វែងគំនិតរបស់ពួកហើយពួកជ្វីហ្វដែលគេផ្ដល់គម្ពីរតាប់ទៅរ៉ោះនិងពួកគ្រឹស្ទានដែលផ្ដល់គម្ពីរតាប់អ៊ីនជីលមិនមែនមកពីរឿងមន្ទិលសង្ស័យទេតែក្រោយពីអល់ឡោះបានតែងតាំងណាពីមូហាំម៉ាត់ហើយអ្នកខ្លះមានជំនឿហើយខ្លះទៀតបដិសេធមិនព្រមជឿដោយពួកគេដឹងច្បាស់ថាវាជាការពិត។

5 ស្ដែងចេញនូវបទល្មើសនឹងភាពរឹងចចេសរបស់ពួកជ្វីហ្វនិងពួកគ្រឹស្ទានដោយពួកគេមិនត្រូវបានគេបញ្ជាឱ្យធ្វើអ្វីទេនៅក្នុងគម្ពីគួរអានក្រៅពីអ្វីដែលត្រូវបានគេបញ្ជារនៅក្នុងគម្ពីរបស់ពួកគេអំពីការគោរពសក្ការៈចំពោះអល់ឡោះដោយចិត្តស្មោះស និងជៀសវាងពីប្រការស្ហ៊ីរិកនិងប្រតិបត្តិសឡាតព្រមទាំងបរិច្ចាគហ្សាកាត់នោះឡើយ។ ហើយនោះគឺជាសាសនាដ៏ត្រឹមត្រូវដែលគ្មានវៀចវេឡើយ។

إِنَّ ٱلَّذِينَ كَفَرُوا۟ مِنْ أَهْلِ ٱلْكِتَـٰبِ وَٱلْمُشْرِكِينَ فِى نَارِ جَهَنَّمَ خَـٰلِدِينَ فِيهَآ ۚ أُو۟لَـٰٓئِكَ هُمْ شَرُّ
ٱلْبَرِيَّةِ ﴿٦﴾ إِنَّ ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّـٰلِحَـٰتِ أُو۟لَـٰٓئِكَ هُمْ خَيْرُ ٱلْبَرِيَّةِ ﴿٧﴾
جَزَآؤُهُمْ عِندَ رَبِّهِمْ جَنَّـٰتُ عَدْنٍ تَجْرِى مِن تَحْتِهَا ٱلْأَنْهَـٰرُ خَـٰلِدِينَ فِيهَآ أَبَدًا ۖ رَّضِىَ ٱللَّهُ
عَنْهُمْ وَرَضُوا۟ عَنْهُ ۚ ذَٰلِكَ لِمَنْ خَشِىَ رَبَّهُۥ ﴿٨﴾

6 ពិតប្រាកដណាស់ពួកដែលគ្មានជំនឿនៃពួកជ្វីហ្វនិងពួកគ្រឹស្ទាននិងពួកមូស្ហរីគីននឹងចូលឋាននរកជើហាន់ណាំនៅក្នុងថ្ងៃបរលោកដោយស្ថិតនៅក្នុងនោះជាអមតៈ។ពួកទាំងនោះគឺជាពួកដែលអាក្រក់បំផុតនៃសត្វលោក។ដោយសារពួកគេប្រឆាំងនឹងអល់ឡោះនិងបដិសេធនិងណាពីរបស់ទ្រង់។

7 ហើយបណ្ដាអ្នកដែលមានជំនឿនិងបានសាង អំពើល្អត្រឹមត្រូវ។អ្នកទាំងនោះគឺជាអ្នកដែលល្អបំផុតនៃសត្វលោក។

8 ការតបស្នងរបស់ពួកគេពីម្ចាស់របស់ពួកគេគឺឋានសួគ៌ដែលមានទន្លេជាច្រើនហូរពីក្រោមវិមាននិងដើមឈើរបស់ពួកគេហើយពួកគេស្ថិតនៅទីនោះជាអមតៈ។ ដោយសារពួកគេមានជំនឿនិងអនុវត្តតាមទ្រង់។អល់ឡោះបានយល់ព្រមជាមួយពួកគេ។ហើយពួកគេក៏បានយល់ព្រមជាមួយទ្រង់វិញដែរ។ការតបស្នងនេះគឺសម្រាប់អ្នកដែលកោតខ្លាចម្ចាស់របស់គេ។

## អាល់ហ្សាល់ហ្សាឡះ

**គោលបំណងនៃស៊ូរ៉ោះ** ភាពភ័យញ័ររបេះដូងនៃពួកធ្វេសប្រហែសនៅពេលដែលដឹងច្បាស់ពីការកាត់ក្ដីនិងការជំនុំជំរះយ៉ាងតឹងរឹងបំផុត។

**តាហ្សៀរ**



إِذَا زُلْزِلَتِ ٱلْأَرْضُ زِلْزَالَهَا ﴿١﴾ وَأَخْرَجَتِ ٱلْأَرْضُ أَثْقَالَهَا ﴿٢﴾ وَقَالَ ٱلْإِنسَٰنُ مَا لَهَا ﴿٣﴾
يَوْمَئِذٍ تُحَدِّثُ أَخْبَارَهَا ﴿٤﴾ بِأَنَّ رَبَّكَ أَوْحَىٰ لَهَا ﴿٥﴾ يَوْمَئِذٍ يَصْدُرُ ٱلنَّاسُ أَشْتَاتًا لِّيُرَوْا۟ أَعْمَٰلَهُمْ ﴿٦﴾
فَمَن يَعْمَلْ مِثْقَالَ ذَرَّةٍ خَيْرًا يَرَهُۥ ﴿٧﴾ وَمَن يَعْمَلْ مِثْقَالَ ذَرَّةٍ شَرًّا يَرَهُۥ ﴿٨﴾

1 នៅពេលដែលផែនដីរញ្ជួយយ៉ាងខ្លាំងដែលជាការកើតឡើងក្នុងថ្ងៃបរលោក។
2 ផែនដីបានខ្ជាក់ចេញពីក្នុងផ្ទៃរបស់វានូវសាកសពទាំងអស់នឹងអ្វីៗផ្សេងទៀត។
3 មនុស្សបាននិយាយដោយសេចក្ដីងឿងឆ្ងល់ថា៖ហេតុអ្វីបានជាផែនដីរញ្ជួយខ្លាំងបែបនេះ?
4 នៅក្នុងថ្ងៃដ៏អស្ចារ្យនោះផែនដីបានប្រាប់ពីអ្វីដែលបានប្រព្រឹត្តនៅលើវាអំពីប្រការល្អនិងអាក្រក់។
5 ពីព្រោះអល់ឡោះបានប្រាប់ឱ្យវាដឹងនិងបញ្ជាឱ្យវាធ្វើដូច្នោះ។
6 នៅក្នុងថ្ងៃដ៏អស្ចារ្យនោះផែនដីរញ្ជួយហើយបញ្ចេញមនុស្សលោកចេញពីផ្នូររបស់ពួកគេដើរសំដៅទៅកាន់កន្លែងកាត់សេចក្ដីជាក្រុមៗដើម្បីទៅមើលនូវទង្វើទាំងឡាយរបស់ពួកគេដែលបានសាងនៅលោកិយ៍។
7 អ្នកដែលធ្វើអំពើល្អសូម្បីមានទម្ងន់ប៉ុនលំអងធូលីក៏គេនឹងឃើញវាដែរ។
8 ចំណែកឯអ្នកដែលធ្វើអំពើអាក្រក់សូម្បីមានទម្ងន់ប៉ុនលំអងធូលីក៏គេនឹងមើលឃើញវាដែរ។

## អាល់អាទីយ៉ាត

**គោលបំណងនៃស៊ូរ៉ោះ:** បញ្ជាក់ពីលក្ខណសម្បត្តិរបស់មនុស្សដែលយកចិត្តទុកដាក់ខ្លាំងលើលោកិយនេះហើយរំលឹកគេពីលទ្ធផលចុងក្រោយរបស់គេនិងធ្វើឱ្យគេរស់ឡើងវិញដើម្បីបញ្ជាក់ពីដំណើររបស់ពួកគេ។

**តាហ្វសៀរ**

وَٱلْعَٰدِيَٰتِ ضَبْحًا ﴿١﴾ فَٱلْمُورِيَٰتِ قَدْحًا ﴿٢﴾ فَٱلْمُغِيرَٰتِ صُبْحًا ﴿٣﴾ فَأَثَرْنَ بِهِۦ نَقْعًا ﴿٤﴾
فَوَسَطْنَ بِهِۦ جَمْعًا ﴿٥﴾ إِنَّ ٱلْإِنسَٰنَ لِرَبِّهِۦ لَكَنُودٌ ﴿٦﴾ وَإِنَّهُۥ عَلَىٰ ذَٰلِكَ لَشَهِيدٌ ﴿٧﴾
وَإِنَّهُۥ لِحُبِّ ٱلْخَيْرِ لَشَدِيدٌ ﴿٨﴾ أَفَلَا يَعْلَمُ إِذَا بُعْثِرَ مَا فِى ٱلْقُبُورِ ﴿٩﴾
وَحُصِّلَ مَا فِى ٱلصُّدُورِ ﴿١٠﴾ إِنَّ رَبَّهُم بِهِمْ يَوْمَئِذٍ لَّخَبِيرٌۢ ﴿١١﴾

1 អល់ឡោះស្បថនឹងសត្វសេះទាំងឡាយដែលរត់ទាំងដង្ហក់យ៉ាងខ្លាំងនៅក្នុងសមរភូមិ។
2 ហើយទ្រង់ស្បថនឹងសត្វសេះដែលរត់យ៉ាងលឿនចេញផ្កាភ្លើងតាមក្រចករបស់វានៅពេលវាជាន់លើដីនឹងដុំថ្មពេញទំហឹង។
3 ហើយទ្រង់ស្បថនឹងសត្វសេះដែលវាបោលសម្រុកទៅខ្មាំងសត្រូវទាំងព្រឹកព្រលឹម។
4 វាធ្វើឱ្យធុលីហុយហុយទ្រលោមនៅខាងមុខសត្រូវពេលកំពុងធ្វើសង្គ្រាម។
5 ហើយពួកវាសម្រុកចូលទៅកណ្ដាលហ្វូងសត្រូវ ។
6 ពិតប្រាកដណាស់មនុស្សលោកគឺរមិលគុណចំពោះម្ចាស់របស់គេ។
7 គេធ្វើជាសាក្សីលើខ្លួនឯងចំពោះការរមិលគុណនេះ។គេមិនអាចប្រកែកបានឡើយដោយសារវាបានស្តែងចេញមកយ៉ាងច្បាស់លាស់។
8 គេស្រលាញ់ទ្រព្យសម្បត្តិយ៉ាងងុបងល់ហើយកំណាញ់នឹងការបរិច្ចាគវា។





9 តើមនុស្សលោកដែលស្រលាញ់ការរស់នៅលើលោកិយ៍មិនដឹងទេឬថានៅពេលដែលអល់ឡោះបញ្ចេញសាកសពពួកគេពីក្នុងផ្នូរមកវិញត្រូវដើម្បីជំនុំជំរះហើយកិច្ចនោះមិនដូចអ្វីដែលពួកគេគិតនោះទេ?

10 គេនឹងលាតត្រដាងនូវអ្វីដែលនៅក្នុងចិត្តនិងជំនឿរបស់ពួកគេ។

11 ពិតប្រាកដណាស់នៅថ្ងៃនោះម្ចាស់របស់ពួកគេដឹងបំផុតចំពោះរឿងរ៉ាវរបស់ពួកគេ។គ្មានអ្វីអាចលាក់បាំងនឹងទ្រង់បានឡើយហើយទ្រង់នឹងតបស្នងទៅតាមអ្វីដែលពួកគេបានប្រព្រឹត្តិ។

## អាល់ការីអះ

**គោលបំណងនៃស៊ូរោះ** ភាពញាប់ញ័រនៃបេះដូងដោយសារការមកដល់នៅថ្ងៃបរលោក។

**តាហ្សៀរ**

ٱلۡقَارِعَةُ ١ مَا ٱلۡقَارِعَةُ ٢ وَمَآ أَدۡرَىٰكَ مَا ٱلۡقَارِعَةُ ٣ يَوۡمَ يَكُونُ ٱلنَّاسُ كَٱلۡفَرَاشِ ٱلۡمَبۡثُوثِ
٤ وَتَكُونُ ٱلۡجِبَالُ كَٱلۡعِهۡنِ ٱلۡمَنفُوشِ ٥ فَأَمَّا مَن ثَقُلَتۡ مَوَٰزِينُهُۥ ٦ فَهُوَ فِي عِيشَةٖ رَّاضِيَةٖ ٧
وَأَمَّا مَنۡ خَفَّتۡ مَوَٰزِينُهُۥ ٨ فَأُمُّهُۥ هَاوِيَةٞ ٩ وَمَآ أَدۡرَىٰكَ مَا هِيَهۡ ١٠ نَارٌ حَامِيَةُۢ ١١

1 ពេលវេលាដែលអង្រួនដួងចិត្តមនុស្សលោកឱ្យភ័យរន្ធត់។

2 តើអ្វីទៅជាពេលវេលាដែលអង្រួនដួងចិត្តមនុស្សលោកឱ្យភ័យរន្ធត់?

3 តើអ្វីដែលធ្វើឱ្យអ្នកដឹងថាពេលវេលាដែលអង្រួនដួងចិត្តមនុស្សលោកឱ្យភ័យរន្ធត់នោះជាអ្វី?

4 វាគឺជាថ្ងៃដែលមនុស្សលោកញាប់ញ័រភ័យរន្ធត់ប្រៀបដូចជាហ្វូងសត្វមេអំបៅដែលហើរប្រសេចប្រសាច។

5 ហើយភ្នំទាំងឡាយប្រៀបដូចជារោមសត្វចម្រុះពណ៌ដែលប៉ើងរប៉ាត់រប៉ាយ។

6 រីឯអ្នកដែលទង្វើល្អរបស់គេវាធ្ងន់ជាងអំពើអាក្រក់។

7 គេស្ថិតនៅក្នុងការរស់នៅដ៏ជាទីគាប់ចិត្តគឺការរស់នៅក្នុងឋានសួគ៌។

8 ហើយចំណែកឯអ្នកណាដែលអំពើអាក្រក់របស់គេធ្ងន់ជាងអំពើល្អនោះ។

9 ទីលំនៅរបស់គេនៅថ្ងៃបរលោកគឺនៅក្នុងឋាននរក។

10 តើអ្វីដែលធ្វើឱ្យអ្នកដឹងថាវាជាអ្វីនោះ?

11 ជាភ្លើងនរកដ៏សែនក្តៅ។

## អាត់តាកាស៊ួរ

**គោលបំណងនៃស៊ូរោះ** រំលឹកដល់អ្នកដែលរវល់នឹងលោកិយ៍ពីការស្លាប់និងជំនុំជំរះ។

**តាហ្សៀរ**

أَلۡهَىٰكُمُ ٱلتَّكَاثُرُ ١ حَتَّىٰ زُرۡتُمُ ٱلۡمَقَابِرَ ٢ كَلَّا سَوۡفَ تَعۡلَمُونَ ٣ ثُمَّ كَلَّا سَوۡفَ تَعۡلَمُونَ ٤ كَلَّا لَوۡ تَعۡلَمُونَ
عِلۡمَ ٱلۡيَقِينِ ٥ لَتَرَوُنَّ ٱلۡجَحِيمَ ٦ ثُمَّ لَتَرَوُنَّهَا عَيۡنَ ٱلۡيَقِينِ ٧ ثُمَّ لَتُسۡـَٔلُنَّ يَوۡمَئِذٍ عَنِ ٱلنَّعِيمِ ٨

1 អំនួតដាក់គ្នាពីរឿងទ្រព្យសម្បត្តិនិងរឿងកូនចៅធ្វើឱ្យពួកអ្នកភ្លេចគិតពីការគោរពប្រតិបត្តិចំពោះអល់ឡោះ។

2 រហូតពួកអ្នកស្លាប់ហើយចូលទៅក្នុងផ្នូរ។

3 អ្វីដែលនាំឱ្យពួកអ្នកមានមោទនភាពរហូតដល់ភ្លេចគោរពសក្ការៈអល់ឡោះ។ ពួកអ្នកគង់តែនឹងដឹងជាមិនខាននូវលទ្ធផលចុងក្រោយនៃការធ្វើបែបនេះ?

4 ហើយពួកអ្នកគង់តែនឹងដឹងជាមិនខាននូវលទ្ធផលចុងក្រោយ?



5 ជាការពិតប្រសិនបើពួកអ្នកដឹងច្បាស់ថាពួកអ្នកនឹងត្រូវរស់ឡើងវិញត្រឡប់ទៅរកអល់ឡោះនោះហើយទ្រង់នឹងតបស្នងតាមទង្វើរបស់ពួកអ្នកនោះ។ពួកអ្នកពិតជាមិនអំនួតជាក់គ្នាពីរឿងទ្រព្យសម្បត្តិនិងរឿងកូនចៅឡើយ។
6 ជាការពិតណាស់ពួកអ្នកនឹងឃើញភ្លើងនរកនៅថ្ងៃបរលោកជាមិនខាន។
7 បន្ទាប់មកពួកអ្នកពិតជានឹងឃើញវាយ៉ាងច្បាស់នឹងភ្នែកដោយគ្មានសង្ស័យឡើយ។
8 បន្ទាប់មកនៅថ្ងៃនោះអល់ឡោះនឹងសួរពួកអ្នកអំពីរាល់នៀកម៉ាត់ទាំងឡាយដែលទ្រង់ប្រទានឱ្យពួកអ្នកដូចជាសុខភាពល្អនិងទ្រព្យសម្បត្តិស្តុកស្តម្ភនិងអ្វីផ្សេងទៀត។

## អាល់អាសរ៍

**គោលបំណងនៃស៊ូរ៉ោះ:** បញ្ជាក់ពីការចំនេញនិងខាត់នៅក្នុងជីវិតនិងការប្រុងប្រយ័ត្នពីសារសំខាន់នៃពេលវេលារស់នៅរបស់មនុស្សលោក។

**តាហ្សៀរ**

وَٱلْعَصْرِ ① إِنَّ ٱلْإِنسَٰنَ لَفِى خُسْرٍ ②
إِلَّا ٱلَّذِينَ ءَامَنُوا۟ وَعَمِلُوا۟ ٱلصَّٰلِحَٰتِ وَتَوَاصَوْا۟ بِٱلْحَقِّ وَتَوَاصَوْا۟ بِٱلصَّبْرِ ③

1 អល់ឡោះស្បថនឹងពេលវេលាអាសើរ។
2 ពិតណាស់មនុស្សទាំងឡាយឋិតនៅក្នុងការខាតបង់និងវិនាស។
3 លើកលែងតែបណ្តាអ្នកដែលមានជំនឿចំពោះអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់ហើយបានសាងអំពើល្អត្រឹមត្រូវនិងបានផ្តែផ្តាំគ្នាឱ្យប្រកាន់ខ្ជាប់នូវការពិតនិងបានផ្តែផ្តាំគ្នាឱ្យមានការអត់ធ្មត់បុំណ្ណោះ។ហើយអ្នកដែលមានលក្ខណៈសម្បត្តិបែបនេះគឺជាអ្នកដែលជោគជ័យទាំងក្នុងជីវិតលោកិយនិងថ្ងៃបរលោក។

## អាល់ហ៊ូម៉ាហ្សះ

**គោលបំណងនៃស៊ូរ៉ោះ**

ការព្រមានយ៉ាងខ្លាំងក្លាចំពោះអ្នកដែលមើលងាយសាសនាឥស្លាមនិងក្រុមរបស់វា។

**តាហ្សៀរ**

وَيْلٌ لِّكُلِّ هُمَزَةٍ لُّمَزَةٍ ① ٱلَّذِى جَمَعَ مَالًا وَعَدَّدَهُۥ ② يَحْسَبُ أَنَّ مَالَهُۥٓ أَخْلَدَهُۥ ③
كَلَّا ۖ لَيُنۢبَذَنَّ فِى ٱلْحُطَمَةِ ④ وَمَآ أَدْرَىٰكَ مَا ٱلْحُطَمَةُ ⑤ نَارُ ٱللَّهِ ٱلْمُوقَدَةُ ⑥
ٱلَّتِى تَطَّلِعُ عَلَى ٱلْأَفْـِٔدَةِ ⑦ إِنَّهَا عَلَيْهِم مُّؤْصَدَةٌ ⑧ فِى عَمَدٍ مُّمَدَّدَةٍۭ ⑨

1 គឺវិនាសនិងទារុណកម្មយ៉ាងខ្លាំងក្លាចំពោះអ្នកនិយាយដើមគេនិងមួលបង្កាច់គេ។
2 ជាអ្នកដែលគោលបំណងរបស់វាគឺប្រមូលទ្រព្យសម្បត្តិនិងរាប់ចំនួនរបស់វាពួកគេគ្មានគោលបំណងអ្វីផ្សេងពីនោះឡើយ។
3 ដោយគេគិតថាទ្រព្យសម្បត្តិរបស់គេពិតជាធ្វើឱ្យគេគេចផុតពីសេចក្តីស្លាប់និងរស់នៅលើលោកិយគង់វង្សជារៀងហូត។
4 មិនដូច្នេះទេ!តាមពិតគេនឹងបោះវាទៅក្នុងភ្លើងនរកដែលបំផ្លាញទាំងអស់អ្វីដែលធ្លាក់ទៅក្នុងវា។
5 តើអ្វីដែលធ្វើឱ្យអ្នកដឹងថាភ្លើងនរកដែលបំផ្លាញទាំងអស់អ្វីដែលធ្លាក់ទៅក្នុងវានោះជាអ្វី?
6 គឺជាភ្លើងរបស់អល់ឡោះដែលបានបង្កាត់ឆេះសន្ធោសន្ធៅ។
7 ដែលឆាបឆេះរាលរាលពេញខ្លួនប្រាណរហូតដល់បេះដូងរបស់ពួកគេ។

8 ទ្វារនរកទាំងអស់ត្រូវបានបិទជិតដើម្បីកុំឱ្យពួកអ្នកត្រូវទារុណកម្មចេញ។
9 ពួកគេត្រូវចងភ្ជាប់នឹងសសរដ៏វែងនិងរឹងមាំមិនអាចចេញបានឡើយ។

## អាល់ហ្វីល

**គោលបំណងនៃស៊ូរ៉ោះ:** ការផ្តោតលើការបង្ហាញពីឧត្តមភាពរបស់អល់ឡោះលើការថែរក្សាកាក់ហ្ពះ។ហើយជាការរំលឹកនិងថ្លែងអំណរគុណ។

**តាហ្វសៀរ**

أَلَمۡ تَرَ كَيۡفَ فَعَلَ رَبُّكَ بِأَصۡحَٰبِ ٱلۡفِيلِ ١ أَلَمۡ يَجۡعَلۡ كَيۡدَهُمۡ فِي تَضۡلِيلٖ ٢
وَأَرۡسَلَ عَلَيۡهِمۡ طَيۡرًا أَبَابِيلَ ٣ تَرۡمِيهِم بِحِجَارَةٖ مِّن سِجِّيلٖ ٤ فَجَعَلَهُمۡ كَعَصۡفٖ مَّأۡكُولِۭ ٥

1 តើអ្នក(មូហាំម៉ាត់)មិនបានដឹងទេឬថា៖ម្ចាស់របស់អ្នកបានធ្វើទៅលើអាពរ៉ោះនិងក្រុមទ័ពដំរីយ៉ាងដូចម្តេចនៅពេលដែលពួកគេចង់កំទេចកាក់ហ្ពះ?
2 ពិតណាស់អល់ឡោះបានធ្វើឱ្យឧបាយកលអាក្រក់ចង់កំទេចកាក់ហ្ពះរបស់ពួកគេបរាជ័យ។ពួកគេមិនទទួលបាននូវអ្វីដែលពួកគេប៉ងចង់ឱ្យមនុស្សចេញពីកាក់ហ្ពះឡើយ។
3 ហើយទ្រង់បានបញ្ជូនបក្សីទាំងហ្វូងៗទៅប្រយុទ្ធតទល់នឹងពួកគេ។
4 ពួកវាទម្លាក់ទៅលើពួកគេដោយដុំថ្មស៊ីចជ្ជីលដុំថ្មនោះធ្វើពីដីឥដ្ឋដែលចំហុយនៅក្នុងភ្លើងនរក។
5 ហើយអល់ឡោះបានធ្វើឱ្យពួកគេវិនាសដាច់ដោចដូចជាស្មៅដែលត្រូវសត្វស៊ីដាច់ខ្ទេចខ្ទី។

## គូរ៉ៃស្ហ

**គោលបំណងនៃស៊ូរ៉ោះ:**
ការកោតសរសើរដល់ពួកគូរ៉ៃស្ហនិងអ្វីដែលសាកសម្យសម្រាប់ពួកគេ។

**តាហ្វសៀរ**

لِإِيلَٰفِ قُرَيۡشٍ ١ إِۦلَٰفِهِمۡ رِحۡلَةَ ٱلشِّتَآءِ وَٱلصَّيۡفِ ٢
فَلۡيَعۡبُدُواْ رَبَّ هَٰذَا ٱلۡبَيۡتِ ٣ ٱلَّذِيٓ أَطۡعَمَهُم مِّن جُوعٖ وَءَامَنَهُم مِّنۡ خَوۡفِۭ ٤

1 ជាទម្លាប់នៃកុលសម្ព័ន្ធគូរ៉ៃស្ហ។
2 ទម្លាប់របស់ពួកគេគឺការធ្វើដំណើរជួញដូរក្នុងរដូវរងារនៅប្រទេសយ៉េមែននិងការធ្វើដំណើរជួញដូរក្នុងរដូវក្តៅនៅប្រទេសស្ហាមដោយសុវត្ថិភាព។
3 ចូរឱ្យពួកគេគោរពសក្ការៈចំពោះអល់ឡោះជាម្ចាស់គ្រប់គ្រងកាក់ហ្ពះតែមួយគត់។ហើយទ្រង់បានផ្តល់ភាពងាយស្រួលក្នុងការធ្វើដំណើរជួញដូររបស់ពួកគេហើយពួកគេមិនយកនេណាម្នាក់មកធ្វើស្ហ៊ីរិកជាមួយនឹងទ្រង់ឡើយ។
4 ទ្រង់ជាអ្នកផ្តល់ចំណីអាហារដល់ពួកគេដើម្បីបំបាត់នូវការស្រេកឃ្លាននិងផ្តល់សន្តិភាពដល់ពួកគេឱ្យរួចផុតពីការភ័យខ្លាច។ដោយសារក្នុងចិត្តរបស់ពួកអារ៉ាប់បានឱ្យតម្លៃទឹកដីដ៏ពិសិដ្ឋនេះ។

## អាល់ម៉ាអ៊ូន

**គោលបំណងនៃស៊ូរ៉ោះ:**
បង្ហាញពីចរិករបស់ពួកដែលប្រឆាំងនឹងសាសនានិងថ្ងៃបរលោកដើម្បីផ្តល់ការប្រុងប្រយ័ត្នចំពោះអ្នកមានជំនឿនិងផ្តល់ក្តីអាក្រក់ដល់ពួកដែលប្រឆាំង។

**តាហ្វសៀរ**




أَرَءَيۡتَ ٱلَّذِي يُكَذِّبُ بِٱلدِّينِ ١ فَذَٰلِكَ ٱلَّذِي يَدُعُّ ٱلۡيَتِيمَ ٢
وَلَا يَحُضُّ عَلَىٰ طَعَامِ ٱلۡمِسۡكِينِ ٣ فَوَيۡلٞ لِّلۡمُصَلِّينَ ٤
ٱلَّذِينَ هُمۡ عَن صَلَاتِهِمۡ سَاهُونَ ٥ ٱلَّذِينَ هُمۡ يُرَآءُونَ ٦ وَيَمۡنَعُونَ ٱلۡمَاعُونَ ٧

1 តើអ្នកបានឃើញអ្នកដែលបដិសេធនឹងថ្ងៃជំនុំជម្រះដែរឬទេ ?
2 វានោះហើយគឺជាបុគ្គលដែលរំលោភសិទ្ធិកូនកំព្រាយ៉ាងខ្លាំងក្លា។
3 ហើយមិនជម្រុញខ្លួនឯងនិងអ្នកដទៃឱ្យបរិច្ចាគចំណីអាហារដល់អ្នកក្រីក្រឡើយ។
4 ភាពវិនាសអន្តរាយនិងទារុណកម្មគឺសម្រាប់ពួកដែលសឡាត។
5 ពួកដែលព្រងើយកន្តើយចំពោះការសឡាតរបស់ពួកគេ។ពួកគេបណ្តោយពេលសឡាតរហូតដល់ផុតម៉ោងសឡាត។
6 ពួកគេគឺជាពួកដែលសឡាតនិងសាងអំពើល្អដើម្បីចង់បង្ហាញឱ្យគេឃើញតែប៉ុណ្ណោះ។មិនបានធ្វើដោយចិត្តស្មោះសរចំពោះអល់ឡោះឡើយ។
7 ហើយពួកគេជួយដល់អ្នកដទៃឡើយបើទោះបីជាការជួយនោះមិនផ្តល់ផលប៉ះពាល់ដល់រូបគេក៏ដោយ។

## អាល់កាវសើរ

**គោលបំណងនៃស៊ូរ៉ោះ**អល់ឡោះបានផ្តល់សេចក្តីល្អជាច្រើនដល់ណាពីម៉ូហាំម៉ាត់ និងកាត់ផ្តាច់មាគ៌ាបណ្តាអ្នកដែលស្អប់ខ្ពើម។

**តាហ្វសៀរ**

إِنَّآ أَعۡطَيۡنَٰكَ ٱلۡكَوۡثَرَ ١ فَصَلِّ لِرَبِّكَ وَٱنۡحَرۡ ٢ إِنَّ شَانِئَكَ هُوَ ٱلۡأَبۡتَرُ ٣

1 ពិតប្រាកដណាស់យើងបានប្រទានឱ្យអ្នក(មូហាំម៉ាត់)នូវប្រការល្អជាច្រើនក្នុងនោះគឺមានទន្លេអាល់កាវសើរមួយនៅក្នុងឋានសួគ៌។
2 ចូរថ្លែងអំណរគុណទៅចំពោះនៀកម៉ាត់នេះដោយអ្នកសឡាតនិងសំឡេះសត្វដើម្បីម្ចាស់របស់អ្នកតែមួយគត់។
3 ពិតណាស់បុគ្គលដែលស្អប់ខ្ពើមអ្នកគឺបុគ្គលនោះនឹងត្រូវកាត់ផ្តាច់ពីប្រការល្អទាំងអស់។

## អាល់កាហ្វីរ៉ូន

**គោលបំណងនៃស៊ូរ៉ោះ** ផ្តោតទៅលើការទទួលយកការគោរពសក្ការៈតែមួយគត់និងការជ្រះស្អាតពីប្រការស្ទីរិកហើយនិងបែងចែកយ៉ាងច្បាស់លាស់ពីឥស្លាមនិងការធ្វើស្ទីរិក។

**តាហ្វសៀរ**

قُلۡ يَٰٓأَيُّهَا ٱلۡكَٰفِرُونَ ١ لَآ أَعۡبُدُ مَا تَعۡبُدُونَ ٢ وَلَآ أَنتُمۡ عَٰبِدُونَ مَآ أَعۡبُدُ ٣
وَلَآ أَنَا۠ عَابِدٞ مَّا عَبَدتُّمۡ ٤ وَلَآ أَنتُمۡ عَٰبِدُونَ مَآ أَعۡبُدُ ٥ لَكُمۡ دِينُكُمۡ وَلِيَ دِينِ ٦

1 ចូរអ្នក(មូហាំម៉ាត់)ពោលចុះថា៖ឱពួកដែលប្រឆាំងនឹងអល់ឡោះ។
2 ខ្ញុំមិនគោរពសក្ការៈចំពោះអ្វីដែលពួកអ្នកគោរពសក្ការៈនោះឡើយអំពីរូបបដិមានោះ។
3 ហើយពួកអ្នកក៏មិនមែនជាអ្នកគោរពសក្ការៈចំពោះអ្វីដែលខ្ញុំគោរពសក្ការៈនោះដែរ។គឺគោរពសក្ការៈអល់ឡោះតែមួយគត់។
4 ហើយខ្ញុំមិនមែនជាអ្នកដែលគោរពសក្ការៈចំពោះអ្វីដែលពួកអ្នកបានគោរពសក្ការៈនោះឡើយអំពីរូបបដិមានោះ។
5 ហើយពួកអ្នកក៏មិនមែនជាអ្នកគោរពសក្ការៈចំពោះអ្វីដែលខ្ញុំគោរពសក្ការៈនោះ

ដែរ។គឺគោរពសក្ការៈអល់ឡោះតែមួយគត់។
(6) សម្រាប់ពួកអ្នកគឺសាសនារបស់ពួកអ្នកដែលពួកអ្នកអះអាងដោយខ្លួនរបស់ពួកអ្នកផ្ទាល់។ហើយសម្រាប់ខ្ញុំគឺសាសនារបស់ខ្ញុំដែលអល់ឡោះបានបញ្ចុះមកឱ្យខ្ញុំ។

## អាន់ណោសរ៍

**គោលបំណងនៃស៊ូរ៉ោះ:** បញ្ជាក់ពីលទ្ធផលចុងក្រោយរបស់ឥស្លាមគឺការជួយសង្គ្រោះនិងការរំដោះហើយនិងអ្វីដែលគេបានដាក់ច្បាប់នៅពេលដែលទទួលបានដូច្នោះក៏ដូចជាការឈានជិតដល់សង្ខារបស់ណាពីមូហាំម៉ាត់។

**តាហ្វសៀរ**

إِذَا جَآءَ نَصۡرُ ٱللَّهِ وَٱلۡفَتۡحُ ① وَرَأَيۡتَ ٱلنَّاسَ يَدۡخُلُونَ فِي دِينِ ٱللَّهِ أَفۡوَاجٗا ②
فَسَبِّحۡ بِحَمۡدِ رَبِّكَ وَٱسۡتَغۡفِرۡهُۚ إِنَّهُۥ كَانَ تَوَّابَۢا ③

(1) នៅពេលដែលជំនួយរបស់អល់ឡោះចំពោះសាសនារបស់អ្នកបានមកដល់វានឹងទទួលបានជ័យជំនះនឹងការរំដោះទីក្រុងម៉ាក្កះ។
(2) អ្នកនឹងបានឃើញមនុស្សចូលឥស្លាមទាំងក្រុមៗ។
(3) ដូរដឹងចោះថានេះជាសញ្ញាបញ្ជាក់ថានឹងការកិច្ចសំខាន់ដែលគេបានតែងតាំងអ្នកមកនោះជិតដល់ទីបញ្ចប់ហើយ។ដូច្នេះចូរអ្នកលើកតម្កើងដោយការសរសើរទៅចំពោះម្ចាស់របស់អ្នកនឹងសុំអភ័យទោសពីទ្រង់។ពិតប្រាកដណាស់ទ្រង់គឺជាអ្នកដែលទទួលយកការសុំអភ័យទោសបំផុត។

## អាល់ម៉ាសាដ

**គោលបំណងនៃស៊ូរ៉ោះ:** ពួចអំបូរនិងទ្រព្យសម្បត្តិមិនបានផ្តល់ផលប្រយោជន៍អ្វីឡើយបើសិនជាគេប្រឆាំងនឹងអល់ឡោះ។

**តាហ្វសៀរ**

تَبَّتۡ يَدَآ أَبِي لَهَبٖ وَتَبَّ ① مَآ أَغۡنَىٰ عَنۡهُ مَالُهُۥ وَمَا كَسَبَ ② سَيَصۡلَىٰ نَارٗا ذَاتَ لَهَبٖ ③
وَٱمۡرَأَتُهُۥ حَمَّالَةَ ٱلۡحَطَبِ ④ فِي جِيدِهَا حَبۡلٞ مِّن مَّسَدِۭ ⑤

(1) ដៃទាំងពីររបស់ឪពុកមាណាពីអាពូឡាហាប់ពិនអាប់ឌុលមុត្តលិបបានវិនាសអន្តរាយហើយប្រសិនបើគេធ្វើបាបទៅលើណាពី។ហើយខ្លួនគេផ្ទាល់ក៏វិនាសដែរ។
(2) ទ្រព្យសម្បត្តិនិងបុណ្យសក្តិនិងកូនចៅរបស់គេមិនអាចការពារគេពីក្តីវិនាសអន្តរាយនិងទារុណកម្មរបស់អល់ឡោះឡើយ។
(3) គេនឹងចូលទៅក្នុងនរកដែលមានអណ្តាតភ្លើងដ៏សន្ធោសន្ធៅនៅក្នុងថ្ងៃបរលោក។
(4) ហើយភរិយារបស់គេអុំម៉ូជើមីលដែលជាអ្នកយកបន្លារាយលើផ្លូវដើម្បីធ្វើបាបមូហាំម៉ាត់ក៏នឹងចូលទៅក្នុងនរកដែលមានអណ្តាតភ្លើងដ៏សន្ធោសន្ធៅនោះដែរ។
(5) ហើយនៅនឹងករបស់នាងមានខ្សែព្រួរសម្រាប់អូសនាងចូលឋាននរក។

## អាល់អៀខឡាស

**គោលបំណងនៃស៊ូរ៉ោះ:** បញ្ជាក់ពីភាពជាម្ចាស់យ៉ាងពេញលេញតែមួយគត់របស់អល់ឡោះហើយជ្រះស្អាតពីភាពខ្វះខាត។

**តាហ្វសៀរ** قُلۡ هُوَ ٱللَّهُ أَحَدٌ ① ٱللَّهُ ٱلصَّمَدُ ②
لَمۡ يَلِدۡ وَلَمۡ يُولَدۡ ③ وَلَمۡ يَكُن لَّهُۥ كُفُوًا أَحَدُۢ ④




1 ចូរអ្នក(មូហាំម៉ាត់)ពោលចុះថា៖អល់ឡោះគឺជាម្ចាស់តែមួយគត់គ្មានម្ចាស់ផ្សេងក្រៅពីទ្រង់ឡើយ។
2 ទ្រង់ជាម្ចាស់មានអានុភាពនិងឧត្តមភាពពេញលេញ។អ្នកដែលត្រូវគេពឹងពាក់នៅពេលមានតម្រូវការចាំបាច់។
3 ទ្រង់មិនបានប្រសូតបុត្រឡើយហើយទ្រង់ក៏មិនត្រូវគេប្រសូតដែរ។ហើយទ្រង់គ្មានបុត្រនិងគ្មានមាតាបិតាឡើយ។
4 ហើយគ្មាននរណាម្នាក់ប្រៀបប្រដូចនឹងទ្រង់ឡើយ។

## អាល់ហ្វាឡ័ក

**គោលបំណងនៃស៊ូរ៉ោះ:**
ការសុំពីអល់ឡោះឱ្យថែរក្សាការពារនិងបញ្ចៀសពីប្រការអាក្រក់ជាក់ស្តែង។

**តាហ្សៀរ**

قُلۡ أَعُوذُ بِرَبِّ ٱلۡفَلَقِ ١ مِن شَرِّ مَا خَلَقَ ٢ وَمِن شَرِّ غَاسِقٍ إِذَا وَقَبَ ٣
وَمِن شَرِّ ٱلنَّفَّٰثَٰتِ فِي ٱلۡعُقَدِ ٤ وَمِن شَرِّ حَاسِدٍ إِذَا حَسَدَ ٥

1 ចូរអ្នក(មូហាំម៉ាត់)ពោលចុះថា៖ខ្ញុំសុំពីម្ចាស់គ្រប់គ្រងពេលទៀបភ្លឺឱ្យបញ្ចៀស។
2 អំពីប្រការអាក្រក់ទាំងឡាយដែលទ្រង់បានបង្កើតមក។
3 សុំពីអល់ឡោះមេត្តាបញ្ចៀសពីអំពើអាក្រក់នៃពេលយប់នៅពេលដែលភាពងងឹតបានមកដល់អំពីសត្វសាហាវនិងចោរ។
4 សុំមេត្តាបញ្ចៀសពីប្រការអាក្រក់របស់ពួកស្ត្រីមេធ្មប់ដែលពួកគេបានសូត្រមន្តអាគមផ្លុំក្នុងចំណងខ្សែគាថារបស់ពួកគេ។
5 សុំមេត្តាបញ្ចៀសពីប្រការអាក្រក់របស់អ្នកច្រណែនឈ្នានីសនៅពេលដែលគេប្រាថ្នាចង់ឱ្យអ្នកដទៃវិនាសបាត់បង់លាភសក្ការៈ។

## អាន់ណាស

**គោលបំណងនៃស៊ូរ៉ោះ:** ការសុំពីអល់ឡោះឱ្យថែរក្សាការពារនិងបញ្ចៀសពីប្រការអាក្រក់របស់ស្ហៃតនការរំខានរបស់វានិងប្រការអាក្រក់ដែលលាក់កំបាំង។

**តាហ្សៀរ** قُلۡ أَعُوذُ بِرَبِّ ٱلنَّاسِ ١ مَلِكِ ٱلنَّاسِ ٢
إِلَٰهِ ٱلنَّاسِ ٣ مِن شَرِّ ٱلۡوَسۡوَاسِ ٱلۡخَنَّاسِ ٤
ٱلَّذِي يُوَسۡوِسُ فِي صُدُورِ ٱلنَّاسِ ٥ مِنَ ٱلۡجِنَّةِ وَٱلنَّاسِ ٦

1 ចូរអ្នក(មូហាំម៉ាត់)ពោលចុះថា៖ខ្ញុំសុំពីម្ចាស់នៃមនុស្សលោក។
2 ដែលជាស្តេចគ្រប់គ្រងមនុស្សលោកទៅតាមក្តីប្រាថ្នារបស់ទ្រង់ហើយគ្មានស្តេចណាផ្សេងក្រៅពីទ្រង់ឡើយ។
3 ជាម្ចាស់ដែលត្រូវគេគោរពសក្ការៈគ្មានម្ចាស់ណាដែលត្រូវគេគោរពសក្ការៈពិតគឺមានតែទ្រង់មួយគត់។
4 ឱ្យបញ្ចៀសពីប្រការអាក្រក់នៃការញុះញង់របស់ពួកស្ហៃតននៅពេលដែលមនុស្សលោកភ្លេចហ្ស៊ីកៀរទៅចំពោះអល់ឡោះនៅពេលគេហ្ស៊ីកៀរចំពោះអល់ឡោះវាលាក់ខ្លួនពួនអាត្មា។
5 ដែលវាញុះញង់អូសទាញនៅក្នុងចិត្តមនុស្សលោក។
6 ហើយពួកវាទាំងនោះមកអំពីជីននិងមនុស្សលោក។





# សំណួរសំខាន់ៗក្នុងជីវិតរស់នៅរបស់អ្នកមូស្លីម

**១- តើអ្នកឥស្លាមជ្រើសយកគោលជំនឿពីប្រភពណា?** អ្នកឥស្លាមជ្រើសយកគោលជំនឿរបស់ពួកគេចេញពីគម្ពីរអាល់គួរអានដែលជាបន្ទូលរបស់ អល់ឡោះ ជាម្ចាស់និងស៊ុណ្ណះដ៏ត្រឹមត្រូវរបស់ណាពី ម៉ូហាំម៉ាត់ ដែលលោកមិនធ្លាប់បាននិយាយអ្វីមួយតាមចំណង់របស់លោកឡើយ។ ក៏ប៉ុន្តែ វាគឺជា វ៉ាហ៊ី ដែល អល់ឡោះ បានផ្តល់ឱ្យលោកដូចដែលទ្រង់បានមានបន្ទូលថា៖ ﴿إِنْ هُوَ إِلَّا وَحْيٌ يُوحَىٰ﴾ មានន័យថា៖ **វា(ពាក្យសំដីដែលគេនិយាយ) គ្មានអ្វីក្រៅពីវ៉ាហ៊ីដែលត្រូវ គេវ៉ាហ៊ីមកនោះឡើយ** (អាន់ណាជម៍ : ៤)។

ទាំងនោះវាសមស្របទៅតាមការយល់ឃើញរបស់ពួក សហាហ្ពាត់ របស់ណាពី ម៉ូហាំម៉ាត់ ហើយនិងពួកបុព្វបុរសជំនាន់ដើមដែលមានកុសលធម៌ដែល អល់ឡោះ បានសន្យាថានឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌។

**២- ពេលយើងខ្វែងគំនិតគ្នា តើយើងត្រូវត្រឡប់ទៅរកអ្វី?**

យើងត្រូវវិលត្រឡប់ទៅរកច្បាប់ដ៏ត្រឹមត្រូវនិងការវិនិច្ឆ័យក្នុងរឿងនេះគឺត្រឡប់ទៅរកគម្ពីរអាល់គួរអានរបស់ អល់ឡោះ ជាម្ចាស់និងស៊ុណ្ណះរបស់រ៉ស៊ូលរបស់ទ្រង់។ ដោយ អល់ឡោះ បានមានបន្ទូលថា៖ ﴿فَإِن تَنَٰزَعۡتُمۡ فِي شَيۡءٖ فَرُدُّوهُ إِلَى ٱللَّهِ وَٱلرَّسُولِ﴾ មានន័យថា៖ **ប្រសិនបើពួកអ្នកខ្វែងគំនិតគ្នាអំពីកិច្ចការអ្វីមួយ ចូរពួកអ្នកយកប្រការនោះត្រឡប់ទៅរក អល់ឡោះ (គម្ពីរអាល់គួរអាន) និងរ៉ស៊ូលុលឡោះ (ស៊ុណ្ណះ)**។(អាន់នីសាក់ : ៥៩)

ចំណែកណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ខ្ញុំបានបន្សល់ទុកឱ្យពួកអ្នកនូវពីរប្រការ ហើយពួកអ្នកនឹងមិនវង្វេងជាដាច់ខាត ដរាបណាពួកអ្នកប្រកាន់ខ្ជាប់នឹងពីរប្រការនេះ គឺគម្ពីររបស់ អល់ឡោះ (គួរអាន) និងមាគ៌ាណាពីរបស់ទ្រង់ (ស៊ុណ្ណះ)**។(អាល់ម៉ូវ៉ាតតក់)

**៣- តើក្រុមណាមួយជាក្រុមដែលទទួលជោគជ័យនាថ្ងៃបរលោក?** ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍៖ មានន័យថា៖ **ពលរដ្ឋរបស់ខ្ញុំនឹងបែកទៅជា៧៣ក្រុម។ ក្រុមទាំងអស់នឹងចុះឋាននរក លើកលែងតែមួយក្រុមតែប៉ុណ្ណោះ។** សហាហ្ពាត់ក៏បានសួរ៖ (តើក្រុមណាទៅឱរ៉ស៊ូលុលឡោះ?) លោកបានឆ្លើយ៖ **ក្រុមណាដែលឈរលើមាគ៌ារបស់ខ្ញុំ និងមាគ៌ារបស់បណ្តា សហាហ្ពាត់ របស់ខ្ញុំ)**។ (អះម៉ាត់)

ផ្លូវដ៏ត្រឹមត្រូវពិតប្រាកដ ដែលយើងត្រូវដើរតាមនោះគឺជាផ្លូវដែលណាពី ម៉ូហាំម៉ាត់ និងសហាហ្ពាត់ របស់លោកធ្លាប់បានដើរ។ ប្រសិនបើអ្នកចង់ទទួលបានភាពជោគជ័យ និងត្រូវគេទទួលយករាល់ អាម៉ាល់ ទាំងឡាយនោះ គឺចាំបាច់លើអ្នកត្រូវប្រកាន់ខ្ជាប់



នឹងផ្លូវនេះ ហើយត្រូវប្រុងប្រយ័ត្នពីប្រការដែលបង្កើតថ្មីនៅក្នុងសាសនាឥស្លាម។
**៤-តើមានលក្ខខណ្ឌអ្វីខ្លះដែលគេទទួលយកអាម៉ាល់(អំពើល្អឬស្មោះស)?** លក្ខខណ្ឌរបស់វាមាន៖ **១- ជំនឿចំពោះ អល់ឡោះ** និងតាវហេតចំពោះទ្រង់តែមួយ ហើយគេមិនទទួលយកអំពើល្អពីជនដែលប្រព្រឹត្តប្រការ ស្ហ៊ីរិក(ពហុទេពនិយម)ឡើយ។ **២- អៀខឡើស(ស្មោះស)** យើងចាំបាច់ត្រូវធ្វើអ្វីមួយ ប្រាថ្នាចង់បានការតបស្នងពី អល់ឡោះ តែមួយគត់។ **៣- អនុវត្តតាមណាពី** ក្នុងការធ្វើអំពើល្អនោះស្របទៅតាមអ្វីលោកបាននាំមក ហើយមិនត្រូវគោរពសក្ការៈចំពោះ អល់ឡោះ ឡើយ លើកលែងតែការគោរពនោះស្របតាមច្បាប់ឥស្លាម។ ប្រសិនបើបាត់នូវលក្ខខណ្ឌណាមួយគឺ អាម៉ាល់ ទាំងឡាយត្រូវគេបដិសេធចោល ហើយគេមិនទទួលយកឡើយ។ អល់ឡោះ បានមានបន្ទូលថា៖ ﴿وَقَدِمْنَآ إِلَىٰ مَا عَمِلُوا۟ مِنْ عَمَلٍ فَجَعَلْنَٰهُ هَبَآءً مَّنثُورًا﴾
មានន័យថា៖ **យើងបានសម្រេចលើអំពើល្អដែលពួកគេបានសាង ហើយយើងធ្វើឱ្យវាលោយសាបសូន្យដូចធូលីដែលរសាត់តាមខ្យល់។** (អាល់ហ្វូរកន : ២៣)
**៥-តើសាសនាតម្រូវឱ្យមានប៉ុន្មានកម្រិតថ្នាក់?** សាសនាឥស្លាមមានបីកម្រិតថ្នាក់គឺ **១-** ឥស្លាម **២-** អ៊ីម៉ាន(ជំនឿ) **៣-** អៀហសាន(កុសលធម៌)។
**៦- តើឥស្លាមជាអ្វី? និងមានរ៉ូកុន(គោលគ្រឹះ)ប៉ុន្មាន?** ឥស្លាម គឺការប្រគល់ខ្លួនចំពោះ អល់ឡោះ ដោយតម្រង់ការគោរពសក្ការៈទាំងឡាយចំពោះទ្រង់ ហើយគោរពបទបញ្ជារបស់ទ្រង់ដោយការអនុវត្តតាម និងត្រូវដកខ្លួនចេញឱ្យឆ្ងាយពីប្រការ ស្ហ៊ីរិក និងពួកអ្នកប្រព្រឹត្តអំពើនេះ។ ឥស្លាមមាន រ៉ូកុន(គោលគ្រឹះ) ចំនួនប្រាំប្រការដូចដែលណាពី ម៉ូហាំម៉ាត់ បានរៀបរាប់ប្រាប់នៅក្នុងប្រសាសន៍របស់លោក៖ មានន័យថា៖ **គេបានស្ថាបនាសាសនាឥស្លាមលើប្រាំប្រការគឺ**
**១- ធ្វើសាក្សីថាគ្មានទេម្ចាស់ដែលត្រូវគោរពសក្ការៈដ៏ត្រឹមត្រូវមានតែ អល់ឡោះ ហើយ ម៉ូហាំម៉ាត់ គឺជាអ្នកនាំសាររបស់ទ្រង់, ២- ប្រតិបត្តិ សឡាត, ៣- បរិច្ចាកហ្សាកាត់, ៤- ធ្វើបុណ្យហាជ្ជ, ៥- បួសក្នុងខែ រ៉ម៉ាហ្ទន**។(អាល់ពូខរី និងមូស្លីម)
**៧- តើអ៊ីម៉ានជាអ្វី? និងមានរ៉ូកុន(គោលគ្រឹះ)ប៉ុន្មាន?** អ៊ីម៉ាន គឺការជឿជាក់យ៉ាងមុតមាំនៅក្នុងចិត្ត ពោលនឹងអណ្តាត និងអនុវត្តនឹងកាយវិការអវយវៈខ្លួនប្រាណ។ អ៊ីម៉ានកើនឡើងដោយការគោរពសក្ការៈ ហើយវាចុះអន់ថយដោយការប្រព្រឹត្តប្រការដែលច្បាប់បានដាក់បម្រាម។ អល់ឡោះ បានមានបន្ទូលថា៖ ﴿لِيَزْدَادُوٓا۟ إِيمَٰنًا مَّعَ إِيمَٰنِهِمْ﴾
មានន័យថា៖ **ដើម្បីឱ្យពួកគេបន្ថែមនូវភាពមានជំនឿ រួមជាមួយនឹងជំនឿរបស់ពួកគេថែមទៀត**។ (អាល់ហ្វាតហ៍ : ៤)
ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **អ៊ីម៉ាន ឬជំនឿនោះមានជាង៧០ផ្នែក។ ជំនឿដែលល្អប្រសើរជាងគេគឺពោល៖** لا إله إلا الله **( ឡា អ៊ីឡា**





ហា អ៊ីល ឡល់ឡោះ) ហើយជំនឿដែលតូច ឬមានកម្រិតទាបបំផុតគឺការរើសអ្វីមួយដែលអាចបង្កឱ្យមានគ្រោះថ្នាក់ចេញអំពីផ្លូវដើរ ហើយសេចក្តីខ្មាសអៀនក៏ជាផ្នែកមួយនៃជំនឿដែរ។(មូស្លីម)

តាមរយៈអ្វីដែលអ្នកឥស្លាមសង្កេតលើខ្លួនឯងនឹងបញ្ជាក់ឃើញថា ខ្លួនឯងឧស្សាហ៍ក្នុងការគោរពប្រតិបត្តិអំពើល្អនៅពេលដែលមានរដូវធ្វើល្អមកដល់ ហើយមានការព្រងើយកន្តើយនៅពេលប្រព្រឹត្តអំពើ ម៉ាក់សៀត។ អល់ឡោះ បានបន្ទូល ៖ ﴿إِنَّ ٱلْحَسَنَٰتِ يُذْهِبْنَ ٱلسَّيِّـَٔاتِ﴾ មានន័យថា៖ **ពិតណាស់ អំពើល្អលុបបំបាត់អំពើអាក្រក់**។ (ហ៊ូទ : ១១៤)

ចំណែក រ៉ូកុន(គោលគ្រឹះ) របស់វាមានប្រាំមួយប្រការ ដូចដែលណាពី មូ៉ហាំម៉ាត់ បានរៀបរាប់ក្នុងប្រសាសន៍របស់លោកថា៖ មានន័យថា៖ **អ្នកត្រូវមានជំនឿចំពោះ អល់ឡោះ បណ្តាម៉ាឡាអ៊ីកាត់របស់ទ្រង់ បណ្តាគីតាបរបស់ទ្រង់ បណ្តារ៉ស៊ូលរបស់ទ្រង់ ថ្ងៃបរលោក និងព្រះលិខិតរបស់ទ្រង់ល្អឬអាក្រក់**។ (អាល់ពូខរី)

**៨- តើ لَا إِلٰهَ إِلَّا اللهُ (ឡា អ៊ីឡាហា អ៊ីល ឡល់ឡោះ) មានអត្ថន័យដូចម្តេច?**

មានន័យថា បដិសេធចោលនូវរាល់ការទាមទារគោរពសក្ការៈទាំងឡាយផ្សេងក្រៅពីអល់ឡោះ ហើយទទួលយកការគោរពសក្ការៈនេះសម្រាប់ អល់ឡោះ តែមួយប៉ុណ្ណោះ។

**៩- តើ អល់ឡោះ នៅជាមួយយើងមែនទេ?** មែន! អល់ឡោះ នៅជាមួយយើង ដោយការដឹងរបស់ទ្រង់ ការឮរបស់ទ្រង់ ការឃើញរបស់ទ្រង់ ការថែរក្សារបស់ទ្រង់ អានុភាពរបស់ទ្រង់ និងការប្រាថ្នារបស់ទ្រង់។ រីឯអត្តៈឬហ្សាតរបស់ទ្រង់វិញគ្មានអ្វីមួយនៃសត្វលោករបស់ទ្រង់អាចគ្របដណ្តប់ទ្រង់ឡើយ។

**១០- តើគេអាចមើលឃើញ អល់ឡោះ ផ្ទាល់នឹងភ្នែកទេ?** អ្នកឥស្លាមទាំងអស់បានឯកភាពគ្នាថាមិនមាននរណាម្នាក់អាចមើលឃើញ អល់ឡោះ នៅក្នុងលោកិយនេះទេ។ បណ្តាអ្នកមានជំនឿនឹងបានឃើញទ្រង់នៅថ្ងៃបរលោកនៅកន្លែងដែលគេប្រមូលផ្តុំមនុស្សនិងនៅក្នុងឋានសួគ៌។ អល់ឡោះ បានមានបន្ទូលថា៖ ﴿وُجُوهٌ يَوْمَئِذٍ نَّاضِرَةٌ ۝٢٢ إِلَىٰ رَبِّهَا نَاظِرَةٌ﴾មានន័យថា៖ **មុខរបស់អ្នកមានជំនឿនៅក្នុងថ្ងៃនោះ(បរលោក) គឺមានពន្លឺចែងចាំង។ ពួកគេមើលទៅកាន់ម្ចាស់របស់ពួកគេ**។(អាល់គីយ៉ាម៉ះ:២២-២៣)

**១១-តើការស្គាល់ព្រះនាមនិងលក្ខណសម្បត្តិរបស់ អល់ឡោះ មានផលប្រយោជន៍អ្វីខ្លះ?** ជាការពិតណាស់ កាតព្វកិច្ចដំបូងបង្អស់ដែល អល់ឡោះ បានដាក់លើខ្ញុំបម្រើទាំងឡាយរបស់ទ្រង់គឺការស្គាល់ទ្រង់។ កាលណាមនុស្សស្គាល់ អល់ឡោះ គឺពួកគេអាចគោរពសក្ការៈចំពោះទ្រង់បានយ៉ាងត្រឹមត្រូវ។ អល់ឡោះ បានមានបន្ទូលថា៖ ﴿فَٱعْلَمْ أَنَّهُۥ لَآ إِلَٰهَ إِلَّا ٱللَّهُ وَٱسْتَغْفِرْ لِذَنۢبِكَ﴾ មានន័យថា៖ **ចូរអ្នក(មូ៉ហាំម៉ាត់)ដឹងចុះថា! ពិតប្រាកដណាស់ គ្មានម្ចាស់ណាផ្សេងដែលត្រូវគោរពសក្ការៈដ៏ពិតប្រាកដ ក្រៅពី អ**




ល់ឡោះឡើយ។ ចូរអ្នកសុំការអភ័យទោសពីទ្រង់ចំពោះបាបកម្មរបស់អ្នក។(មូ៉ហាំម៉ាត់ :១៩) ដូច្នេះ ការរំឭកពីសេចក្តីមេត្តាដ៏ធំធេងរបស់ អល់ឡោះ គឺនាំមកនូវសេចក្តីសង្ឃឹម ហើយរំឭកពីការក្រោធខឹងដ៏ខ្លាំងក្លារបស់ទ្រង់គឺនាំមកនូវការកោតខ្លាច និងរំឭកពីការផ្តល់លាភសក្ការៈគឺមានទ្រង់តែមួយគត់ដែលនាំមកនូវអ្វីដែលត្រូវបានគេដឹងគុណ។ ឯអត្ថន័យនៃការគោរពសក្ការៈចំពោះ អល់ឡោះ តាមរយៈព្រះនាមនិងលក្ខណសម្បត្តិរបស់ទ្រង់គឺសម្រេចដោយការឈ្វេងយល់ពីអត្ថន័យនៃខ្លឹមសាររបស់វានិងការអនុវត្តវា។ អំពីព្រះនាមនិងលក្ខណសម្បត្តិរបស់ទ្រង់ ដែលលក្ខណសម្បត្តិខ្លះគេសរសើរចំពោះមនុស្សដែលមានលក្ខណសម្បត្តិនេះដូចជាចំណេះដឹង ចិត្តមេត្តា និងភាពយុត្តិធម៌។ ឯលក្ខណសម្បត្តិខ្លះទៀតគេស្តីបន្ទោសមនុស្សណាដែលមានលក្ខណសម្បត្តិនេះដូចជាតាំងខ្លួនឯងជាព្រះ មានអំណាចផ្តាច់ការ និងក្រអឺតក្រទម។ សម្រាប់មនុស្សមានលក្ខណសម្បត្តិដែលគេសរសើរដោយគេប្រើឱ្យប្រកាន់យកនូវលក្ខណសម្បត្តិនេះដូចជាទាសភាព ភាពខ្វះខាត តម្រូវការ ឱនលំទោន បួងសួងសុំ។ល។ ក៏ប៉ុន្តែលក្ខណសម្បត្តិបែបនេះគេហាមដាច់ខាតចំពោះព្រះជាម្ចាស់។ ខ្ញុំបម្រើដែលទ្រង់ស្រឡាញ់សព្វព្រះទ័យបំផុតគឺខ្ញុំបម្រើដែលមានលក្ខណសម្បត្តិដែលទ្រង់សព្វព្រះទ័យ។ រីឯអ្នកដែលទ្រង់ក្រោធខឹងជាងគេគឺអ្នកដែលប្រកាន់ចរិតលក្ខណៈដែលទ្រង់ស្អប់ខ្ពើម។

១២- តើព្រះនាមរបស់ អល់ឡោះ ដ៏ប្រពៃមានអ្វីខ្លះ? អល់ឡោះ បានមានបន្ទូលថា៖ ﴿وَلِلَّهِ ٱلْأَسْمَآءُ ٱلْحُسْنَىٰ فَٱدْعُوهُ بِهَا﴾ មានន័យថា៖ បណ្តាឈ្មោះដ៏ល្អប្រពៃជាកម្មសិទ្ធិរបស់ អល់ឡោះ។ ដូច្នេះចូរពួកអ្នកបួងសួងសុំទ្រង់តាមរយៈឈ្មោះទាំងនោះចុះ។(អាល់អាក់រ៉ហ្វ:១៨០) រ៉សូលុលឡោះ បានបញ្ជាក់ផងដែរថា៖ មានន័យថា៖ ពិតណាស់សម្រាប់ អល់ឡោះ នោះគឺ៩៩ឈ្មោះ ខ្វះមួយគ្រប់១០០។ ជនណាទន្ទេញចាំវានឹងចូលឋានសួគ៌។(អាល់ពូខរី និងមូស្លីម)

ការថែរក្សាឈ្មោះទាំងនោះគឺបានន័យថា៖ ១- រក្សាការអានវានិងការរាប់វា។
២-យល់ពីអត្ថន័យរបស់វានិងអ្វីដែលឈ្មោះទាំងនោះចង់បង្ហាញ ហើយមានជំនឿលើវា។ កាលណាគេនិយាយថា៖(الحكيم) គឺគេប្រគល់រាល់កិច្ចការរបស់គេចំពោះអល់ឡោះ។ ពីព្រោះអ្វីគ្រប់យ៉ាងវាអាស្រ័យដោយហិកម៉ាត់(គតិបណ្ឌិត)របស់ទ្រង់។ នៅពេលគេនិយាយថា (القدوس) គឺគេនឹកដល់ភាពពិសិដ្ឋស្អាតស្អំរបស់ទ្រង់ជ្រះស្អាតពីរាល់កង្វះខាតទាំងឡាយ។
៣- ទូអាបួងសួងដោយព្រះនាមរបស់ទ្រង់ ហើយវាមានពីរប្រភេទ។
ក- បួងសួងសរសើនឹងអ៊ីហ្ពាហ្វាត់(គោរពសក្ការៈ)។ ខ- បួងសួងសុំ។

ចំពោះពួកអ្នកដែលតាមដានអាល់គួរអាននិងស៊ុណ្ណះដែលត្រឹមត្រូវគឺគេអាចប្រមូលនូវព្រះនាមរបស់ទ្រង់ដូចតទៅៈ

| ឈ្មោះ | អត្ថន័យ |
|---|---|
| الله<br>អល់ឡោះ | ទ្រង់មានស៊ីហ្វាតអ៊ូលូហ៊ីយ៉ះនិងអ៊ូពូឌីយ៉ះលើសត្វលោករបស់ទ្រង់ទាំងមូល។ ទ្រង់ជាម្ចាស់ដែលត្រូវគេគោរព ជាព្រះ និងជាម្ចាស់ដែលត្រូវគេបន្ទាបខ្លួន និងឱនលំទោន ហើយត្រូវគេឱនក្រាប។ គ្រប់ប្រភេទនៃអ៊ីហ្ពាហ្ពាត់ទាំងអស់ត្រូវឧទ្ទិសថ្វាយចំពោះទ្រង់តែមួយគត់។ |
| الرحمن<br>អាររ៉ោះម៉ាន | ជាព្រះនាមបង្ហាញពីវិសាលភាពនៃក្តីមេត្តារបស់ទ្រង់គ្របដណ្តប់លើសត្វលោកទាំងមូលនៅក្នុងលោកិយនេះ។ ជាព្រះនាមសម្រាប់ អល់ឡោះ តែមួយគត់។ គេមិនអនុញ្ញាតឱ្យយកនាមនេះទៅហៅអ្នកផ្សេងក្រៅពីទ្រង់នោះឡើយ។ |
| الرحيم<br>អាររ៉ហ៊ីម | ទ្រង់មហាមេត្តា មហាអភ័យចំពោះពួកអ្នកមានជំនឿនៅក្នុងលោកិយនេះនិងនៅបរលោក។ ពិតណាស់ ទ្រង់បានចង្អុលបង្ហាញផ្លូវដល់ពួកគេឱ្យគោរពអ៊ីហ្ពាហ្ពាត់ចំពោះទ្រង់ ហើយនៅថ្ងៃបរលោកទ្រង់នឹងលើកតម្កើងពួកគេដោយឱ្យពួកគេបានចូលឋានសួគ៌។ |
| الرءوف<br>អាររ៉អ៊ូហ្វ | ព្រះនាមនេះកម្លាយពីពាក្យ (الرأفة) មានន័យថា ទ្រង់មហាអាណិតនិងមហាមេត្តាដ៏ខ្លាំងក្លាបំផុត។ អាណិតមេត្តាទូទៅចំពោះគ្រប់សត្វលោកទាំងអស់នៅក្នុងលោកិយ ហើយចំពោះពួកគេខ្លះនៅថ្ងៃបរលោក គឺពួកអ្នកដែលមានជំនឿដែលជាវ៉ាលីនិងអាវលីយ៉ាករបស់ទ្រង់។ |
| الغني<br>អាល់ហ្គនី | ទ្រង់មិនត្រូវការដាច់ខាតចំពោះនរណាម្នាក់នៃសត្វលោករបស់ទ្រង់ដោយសារទ្រង់សុក្រឹតពេញលេញបំផុត ហើយលក្ខណសម្បត្តិរបស់ទ្រង់ល្អសុក្រឹតឥតខ្ចោះ។ គ្រប់សត្វលោករបស់ទ្រង់សុទ្ធតែត្រូវការចំពោះទ្រង់ ហើយខ្វះខាតត្រូវការពរជ័យរបស់ទ្រង់និងការជួយសង្គ្រោះរបស់ទ្រង់។ |
| الكريم<br>អាល់កើរីម | ទ្រង់ចម្រើននូវសេចក្តីល្អ ទ្រង់ជាម្ចាស់មហាប្រទាន និងជាអ្នកផ្តល់ឱ្យដ៏មហាឧត្តុង្គឧត្តម។ ទ្រង់ប្រទាននូវអ្វីដែលទ្រង់សព្វព្រះទ័យចំពោះនរណាដែលទ្រង់ពេញចិត្ត ហើយតាមរបៀបដែលទ្រង់សព្វព្រះទ័យដោយការបួងសួងសុំ ឬគ្មានការបួងសួងសុំ។ ទ្រង់អត់ឱនចំពោះទោសកំហុសទាំងឡាយ ហើយបិទបាំងនូវរឿងអាស្រូវរបស់សត្វលោក។ |
| الأكرم<br>អាល់អ៊ឹករ៉ម | ទ្រង់មហាករុណាដ៏កំពូល គ្មានគូប្រៀបដាក់ក្នុងសេចក្តីករុណារបស់ទ្រង់។ សេចក្តីល្អទាំងឡាយមកពីទ្រង់។ ទ្រង់តបស្នងដល់ពួកអ្នកមានជំនឿដោយក្តីប្រទានរបស់ទ្រង់។ ទ្រង់ពន្យារពេលការដាក់ទោសចំពោះពួកអ្នកដែលបដិសេធចំពោះទ្រង់ ហើយទ្រង់ជំនុំជម្រះពួកគេដោយភាពយុត្តិធម៌។ |

| | |
|---|---|
| الوهاب<br>អាល់វ៉ះហើប | ទ្រង់ជាម្ចាស់ចម្រើននូវការផ្តល់អំណោយ ទ្រង់ផ្តល់ឱ្យដោយគ្មានការដោះដូរ ទ្រង់ផ្តល់ឱ្យដោយគ្មានប្រាថ្នាអ្វីពីពួកគេ ទ្រង់ប្រទានឱ្យដោយគ្មានការបួងសួងសុំចំពោះទ្រង់។ |
| الجواد<br>អាល់ជើវ៉ាទ | ទ្រង់ចម្រើននូវការផ្តល់ឱ្យនិងក្តីប្រទានចំពោះសត្វលោករបស់ទ្រង់ ហើយចំពោះពួកអ្នកមានជំនឿដោយក្តីករុណានិងក្តីប្រទានរបស់ទ្រង់ដែលមានចំណែកធំបំផុតសម្រាប់ពួកគេ។ |
| الواسع<br>អាល់វ៉ាស៊ីក | លក្ខណសម្បត្តិរបស់ទ្រង់មហាទូលំទូលាយ គ្មាននរណាម្នាក់អាចគណនាពីគុណសម្បត្តិរបស់ទ្រង់ ឧត្តមភាពនិងអំណាចដ៏ទូលំទូលាយរបស់ទ្រង់។ ទ្រង់ទូលំទូលាយក្នុងការអភ័យទោសនិងសេចក្តីមេត្តា ទ្រង់ទូលំទូលាយក្នុងក្តីប្រទាននិងកុលសធម៌របស់ទ្រង់។ |
| المالك<br>អាល់ម៉ាឡឹក | កម្មសិទ្ធិរបស់ទ្រង់មានតាំងពីបុរេ ហើយជាកម្មសិទ្ធិដែលពិតប្រាកដ។ កម្មសិទ្ធិរបស់ទ្រង់មានតាំងពីទ្រង់បង្កើតសត្វលោក គ្មាននរណាមានកម្មសិទ្ធិក្រៅពីទ្រង់។ អ្វីៗទាំងអស់ក្លាយជាកម្មសិទ្ធិរបស់ទ្រង់នៅពេលសត្វលោកទាំងអស់ត្រូវវិនាស។ |
| الملك<br>អាល់មូលក៏ | ទ្រង់មានសិទ្ធិបញ្ជា ហាមឃាត់ និងមានអំណាច។ ទ្រង់ជាអ្នកចាត់ចែងរឿងរ៉ាវសត្វលោកដោយបទបញ្ជានិងសកម្មភាពរបស់ទ្រង់។ គ្មាននរណាម្នាក់មានគុណលើទ្រង់ក្នុងការផ្តល់អំណាចដល់ទ្រង់និងរក្សាការពារទ្រង់។ |
| المليك<br>អាល់ម៉ាលីក | ជាព្រះនាមបង្ហាញពីលក្ខណសម្បត្តិនៃអំណាចដាច់ខាត។ ពាក្យនេះមានន័យទូលំទូលាលើសពីពាក្យ (الملك)(អាល់មូលក៏)។ |
| القدوس<br>អាល់កុទ្ទូស | ទ្រង់ជ្រះស្អាតនិងស្អាតស្អំពីរាល់កង្វះខាតនិងភាពអាប់ឱន ទោះក្នុងរូបភាពណាក៏ដោយ។ ពីព្រោះទ្រង់តែមួយគត់ជាម្ចាស់ដែលមានលក្ខណសម្បត្តិសុក្រឹតឥតខ្ចោះពេញលេញដាច់ខាត។ គ្មានអ្វីប្រៀបប្រដូចនឹងទ្រង់បានឡើយ។ |
| السلام<br>អាស់សាឡាម | ទ្រង់រួចផុតពីរាល់កង្វះខាតនិងភាពអាប់ឱនទាំងឡាយក្នុងហ្សាតរបស់ទ្រង់ លក្ខណសម្បត្តិរបស់ទ្រង់ ព្រះនាមរបស់ទ្រង់ និងសកម្មភាពរបស់ទ្រង់។ រាល់សន្តិភាពទាំងឡាយដែលកើតមាននៅក្នុងលោកិយនេះ និងនៅបរលោកគឺសុទ្ធតែមកពីទ្រង់។ |
| المؤمن<br>អាល់មុមីន | ទ្រង់ជាម្ចាស់ផ្តល់សច្ចភាពដល់ពួករ៉ស៊ូលទាំងឡាយនិងពួកអ្នកដើរតាមពួកគេដោយការធ្វើសាក្សីរបស់ទ្រង់បញ្ជាក់ពីសច្ចភាពសម្រាប់ពួកគេ ហើយនិងភស្តុតាងទាំងឡាយដែលទ្រង់លើកមកបញ្ជាក់ប្រាប់ពីសច្ចភាពរបស់ពួកគេ។ រាល់សេចក្តីសន្តិភាពទាំងឡាយនៅ |





| | |
|---|---|
| | ក្នុងលោកិយនិងបរលោកជាក្តីប្រទានរបស់ទ្រង់។ ទ្រង់ជាអ្នកផ្តល់សេចក្តីសន្តិដល់ពួកអ្នកមានជំនឿទាំងឡាយឱ្យរួចផុតពីភាពអយុត្តិធម៌ ការជិះជាន់ ឬធ្វើឱ្យពួកគេរួចផុតពីទារុណកម្ម ឬធ្វើឱ្យពួកគេរួចផុតពីការភ័យរន្ធត់នៅថ្ងៃបរលោក។ |
| المهيمن<br>អាល់មូហៃមីន | ជាម្ចាស់គ្រប់គ្រងសត្វលោក រក្សាការពារវា ជាសាក្សីលើវា ហើយស្គាល់វាយ៉ាងច្បាស់លាស់។ |
| العزيز<br>អាល់អាហ្ស៊ីស | វាល់អត្ថន័យឥស្សរភាពនិងសេចក្តីថ្លៃថ្នូរសម្រាប់ទ្រង់ ឥស្សរភាពក្នុងអំណាច គ្មាននណាផ្តាញ់ទ្រង់។ ឥស្សរភាពក្នុងការបដិសេធ ទ្រង់មិនត្រូវការនរណាម្នាក់ឡើយ។ ឥស្សរភាពក្នុងការបង្ក្រាបនិងការត្រួតត្រា គ្មាននរណាម្នាក់កម្រើកបានលើកលែងតែមានការអនុញ្ញាតពីទ្រង់។ |
| الجبار<br>អាល់យ៉ាប់ពើរ | ទ្រង់ជាម្ចាស់ដែលចេតនារបស់ទ្រង់គ្មានទំនប់។ គ្រប់សត្វលោកទាំងអស់រណបចំពោះទ្រង់ ឱនលំទោនចំពោះទ្រង់ ស្តាប់បង្គាប់ទ្រង់។ ទ្រង់តធ្នឹងដែលបាក់ ធ្វើឱ្យក្រក្លាយជាមាន ពិបាកទៅជាស្រួល ឈឺទៅជា គ្រោះថ្នាក់ទៅជាល្អ។ |
| المتكبر<br>អាល់ម៉ូតាកាបពៀរ | ទ្រង់គឺជាម្ចាស់មហាឧត្តម ទ្រង់ថ្កុំថ្កើងជ្រះស្អាតពីអ្វីដែលអាក្រក់និងខ្វះខាត ទ្រង់ខ្ពង់ខ្ពស់មិនប្រព្រឹត្តអំពើអយុត្តិធម៌ចំពោះខ្ញុំបម្រើរបស់ទ្រង់។ ទ្រង់មានអំណាចលើអំណួតរបស់សត្វលោក ទ្រង់ជាម្ចាស់ដែលមានលក្ខណ-សម្បត្តិអំណួត។ |
| الكبير<br>អាល់កើពៀរ | ទ្រង់មហាធំក្នុងហ្សាតរបស់ទ្រង់ ស៊ីហ្វាតរបស់ទ្រង់ និងសកម្មភាពរបស់ទ្រង់។ |
| المتعال<br>អាល់ម៉ូតាអាល | ទ្រង់គឺជាម្ចាស់ដែលអ្វីគ្រប់យ៉ាងឱនលំទោនចំពោះភាពខ្ពង់ខ្ពស់របស់ទ្រង់។ គ្មានអ្វីខ្ពស់ជាងទ្រង់ជាច់ខាត។ អ្វីគ្រប់យ៉ាងនៅក្រោមទ្រង់ ឋិតនៅក្រោមអំណាច និងអាជ្ញារបស់ទ្រង់។ |
| الرب<br>អាររ៉បព៏ | ទ្រង់គឺជាម្ចាស់ដែលបីបាច់សត្វលោករបស់ទ្រង់ដោយពរជ័យ ហើយទ្រង់បណ្តុះគេឱ្យរីកចម្រើនជាលំដាប់។ ទ្រង់ជាអ្នកបីបាច់អាវលីយ៉ាក់របស់ទ្រង់ដោយការកែលម្អចិត្តរបស់ពួកគេ។ ទ្រង់គឺជាអ្នកបង្កើតជាម្ចាស់កម្មសិទ្ធិ និងជាព្រះ។ |
| العظيم<br>អាល់អាហ្ស៊ីម | ទ្រង់គឺជាម្ចាស់ដែលមានឧត្តមភាពកំពូលក្នុងហ្សាតរបស់ទ្រង់ ឈ្មោះរបស់ទ្រង់ ស៊ីហ្វាតរបស់ទ្រង់។ ដូច្នេះ ចាំបាច់លើសត្វលោកត្រូវលើកតម្កើងទ្រង់ ហើយលើកតម្កើងបទបញ្ជារបស់ទ្រង់ និងបម្រាមរបស់ទ្រង់។ |
| القادر | ទ្រង់ជាម្ចាស់ដែលមានអានុភាពលើអ្វីគ្រប់យ៉ាង។ គ្មានអ្វីធ្វើឱ្យទ្រង់អ |

| | |
|---|---|
| អាល់ក៏ទៀរ | សមត្ថភាព ទោះនៅលើដីនិងនៅលើមេឃ។ ទ្រង់ជាអ្នកកំណត់ក្រឹត្យក្រមលើអ្វីគ្រប់យ៉ាង។ |
| القدير<br>អាល់កទៀរ | ពាក្យនេះមានន័យដូច (القادر)ដែរ គ្រាន់តែពាក្យ (القدير) មានន័យកំពូលបំផុតក្នុងការសរសើរចំពោះ អល់ឡោះ ជាម្ចាស់។ |
| المقتدر<br>អាល់មុក តាទៀរ | ជាឈ្មោះដែលបញ្ជាក់ពីភាពកំពូលបំផុតនៃអានុភាពរបស់ទ្រង់ជាម្ចាស់ក្នុងការអនុវត្ត ការលិខិតកំណត់ និងការកំណត់ព្រះលិខិតទាំងនោះតាមពុទ្ធិយល់ដឹងពីបុព្វរបស់ទ្រង់។ |
| الخلاق<br>អាល់ខឡ្លាក | ជាឈ្មោះដែលបញ្ជាក់ពីអ្វីដែល អល់ឡោះ បានបង្កើតដ៏ច្រើនបំផុត។ ទ្រង់ជាម្ចាស់ដែលបង្កើតជានិច្ច ហើយទ្រង់នៅតែមានលក្ខណសម្បត្តិដ៏ឧត្តមនេះជារៀងរហូត។ |
| الخالق<br>អាល់ខឡ៊ីក | ទ្រង់ជាអ្នកច្នៃប្រឌិតដ៏កំពូលចំពោះគ្រប់សត្វលោកទាំងឡាយដោយគ្មានគំរូពីមុនមក។ |
| البارئ<br>អាល់ហ្ពារីអ៍ | ទ្រង់ជាអ្នកបង្កើតអ្វីដែលទ្រង់បានកំណត់ និងសម្រេចនៃសត្វលោកទាំងឡាយ ហើយជាអ្នកបង្កើតអ្វីដែលបានកំណត់រួចឱ្យមានកំណើតឡើង។ |
| المصور<br>អាល់មូ៉សៅវីរ | ទ្រង់ជាអ្នកដែលបង្កើតសត្វលោកឱ្យមានរូបភាពដូចអ្វីដែលទ្រង់បានជ្រើសរើសសម្រាប់ពួកគេ ស្របតាមគតិបណ្ឌិតរបស់ទ្រង់ ពុទ្ធិរបស់ទ្រង់ និងក្ដីមេត្តារបស់ទ្រង់។ |
| الأول<br>អាល់អៅវ៉ាឡ | ទ្រង់គឺជាម្ចាស់ដែលគ្មានអ្វីមុនទ្រង់។ ពិតណាស់ សត្វលោកទាំងឡាយកើតឡើងថ្មីដោយការបង្កើតរបស់ទ្រង់។ រីឯទ្រង់វិញ គ្មានការចាប់ផ្ដើមចំពោះវត្តមានរបស់ទ្រង់។ |
| الآخر<br>អាល់អាខិរ | ទ្រង់គឺជាម្ចាស់ដែលគ្មានអ្វីក្រោយទ្រង់។ ទ្រង់ស្ថិតស្ថេរ។ រាល់អ្នកដែលនៅលើដីនឹងវិនាស ហើយវាសនាចុងក្រោយរបស់ពួកគេវិលទៅរកទ្រង់។ វត្តមានរបស់ទ្រង់គ្មានទីបំផុត។ |
| الظاهر<br>អាស្ហហ្ហៀរ | ទ្រង់ខ្ពង់ខ្ពស់លើសអ្វីគ្រប់យ៉ាង។ គ្មានអ្វីខ្ពស់ជាងទ្រង់។ ទ្រង់មានអំណាច និងក្ដោបក្ដាប់លើអ្វីគ្រប់យ៉ាង។ |
| الباطن<br>អាល់ពើតីន | ទ្រង់ជាម្ចាស់ដែលគ្មានអ្វីនៅក្រៅពីពុទ្ធិរបស់ទ្រង់ ទ្រង់នៅជិតបំផុត ទ្រង់គ្របដណ្ដប់លើអ្វីគ្រប់យ៉ាង ទ្រង់កំបាំងពីខ្សែចក្ខុរបស់សត្វលោកទាំងឡាយនៅក្នុងលោកិយនេះ។ |
| السميع<br>អាស់សើ មៀក | ទ្រង់ជាម្ចាស់ដែលការឮរបស់ទ្រង់គ្របដណ្ដប់លើអ្វីគ្រប់យ៉ាងដែលអាថ៌កំបាំង ការខ្សឹបគ្នា រាល់អ្វីដែលបើកចំហ និងលាតត្រដាង។ ពិតណាស់ រាល់សំឡេងទាំងឡាយ ទោះជាល្អិតប៉ុនណាឬធំប៉ុនណា។ |





| | |
|---|---|
| | ទ្រង់ជាម្ចាស់ដែលឆ្លើយតបចំពោះអ្នកដែលទូអាបួងសួងចំពោះទ្រង់។ |
| البصير<br>អាល់ហ្ពើសៀរ | ទ្រង់ជាម្ចាស់ដែលទតឃើញគ្រប់សត្វលោកទាំងឡាយក្នុងពិភពអាថ៌កំបាំងនិងពិភពបើកចំហ ទោះជាកំបាំងប៉ុនណា ឬបើកចំហប៉ុនណា ទោះល្អិតប៉ុនណា ឬធំប៉ុនណា។ |
| العفو<br>អាល់អាហ្វ៊ូ | ទ្រង់លុបលាងអំពើបាប ហើយអត់ឱនអំពើបាប ហើយទ្រង់មិនដាក់ទោសលើអំពើបាបនេះ ដ្បិតខ្ញុំបម្រើរបស់ទ្រង់ស័ក្តិសមនឹងត្រូវទទួលទោស។ |
| الغفور<br>អាល់ហ្គហ្វួរ | ទ្រង់ជាម្ចាស់ដែលបិទបាំងទោសកំហុសអ្នកដែលប្រព្រឹត្តខុស មិនបកអាក្រាតគេ ហើយមិនដាក់ទោសគេ។ |
| الغفار<br>អាល់ហ្គហ្វារ | ជាឈ្មោះដែលបញ្ជាក់ពីការអភ័យទោសដ៏ច្រើនលើសលុបរបស់ អល់ឡោះ ចំពោះខ្ញុំបម្រើរបស់ទ្រង់ដែលបានប្រព្រឹត្តអំពើបាប ហើយបួងសួងសុំអភ័យទោស។ |
| الستير<br>អាស់សើតៀរ | ទ្រង់ជាម្ចាស់ដែលបិទបាំងខ្ញុំបម្រើរបស់ទ្រង់ ទ្រង់មិនបក់អាក្រាតគេក្នុងចំណោមសត្វលោករបស់ទ្រង់។ ទ្រង់សព្វព្រះទ័យចង់ឱ្យខ្ញុំបម្រើរបស់ទ្រង់បិទបាំងខ្លួនឯងនិងអ្នកដទៃ ហើយក៏ចង់ឱ្យគេបិទបាំងកេរ្តិ៍ខ្មាសខ្លួនឯងផងដែរ។ |
| الحليم<br>អាល់ហាលីម | ទ្រង់ជាម្ចាស់ដែលមិនប្រញាប់ដាក់ទោសលើខ្ញុំបម្រើរបស់ទ្រង់ ដ្បិតមានអានុភាពលើការដាក់ទោសចំពោះពួកគេ។ មិនតែប៉ុណ្ណោះ ទ្រង់អត់ឱន និងលើកលែងចំពោះពួកគេ បើសិនជាពួកគេសុំទោសទ្រង់។ |
| اللطيف<br>អាល់ឡើតីហ្វ | ទ្រង់ដឹងល្អិតល្អន់នៃអ្វីគ្រប់យ៉ាង គ្មានអ្វីលាក់បាំងពីទ្រង់ឡើយ។ ទ្រង់បញ្ជូនសេចក្តីល្អនិងផលប្រយោជន៍ទៅកាន់ខ្ញុំបម្រើរបស់ទ្រង់ ដោយអាថ៌កំបាំងដោយពួកគេនឹកស្មានមិនដល់។ |
| الوتر<br>អាល់វីតរ៍ | ទ្រង់ជាម្ចាស់តែមួយគត់គ្មានដៃគូចូលរួម។ ទ្រង់ជាម្ចាស់តែមួយដែលគ្មានគ្រូបង្រៀន។ |
| الجميل<br>អាល់ជើមីល | ទ្រង់មហាសោភ័ណក្នុងហ្សាតរបស់ទ្រង់ ស៊ីហ្វាតរបស់ទ្រង់ និងទង្វើរបសទ្រង់ គឺមានសោភ័ណភាពដាច់គេ។ |
| العلي<br>អាល់អាឡី<br>الأعلى<br>អាល់អាក់ឡើ | ទ្រង់មានឋានៈខ្ពង់ខ្ពស់បំផុត មានអំណាចខ្ពស់បំផុត ហ្សាតរបស់ទ្រង់ខ្ពស់បំផុត។ អ្វីគ្រប់យ៉ាងឋិតនៅក្រោមអំណាចនិងអាជ្ញារបស់ទ្រង់ ហើយគ្មានអ្វីនៅលើទ្រង់ជាដាច់ខាត។ |
| الواحد<br>អាល់វ៉ាហ៊ីទ | ទ្រង់តែមួយគត់ជាម្ចាស់ដែលសុក្រឹត្យពេញលេញដាច់ខាត គ្មានដៃគូចូលរួមជាមួយទ្រង់។ គ្មានអ្វីប្រៀបប្រដូចនឹងទ្រង់។ ទ្រង់តែមួយគត់ |

| | |
|---|---|
| الأحد<br>អាល់អាហាទ | ដែលចាំបាច់ត្រូវគេគោរពសក្ការៈ គ្មានដៃគូសម្រាប់ទ្រង់។ |
| الصمد<br>អាសស្វម៉ាទ | ទ្រង់គឺជាម្ចាស់ដែលមានអំណាចគ្រប់គ្រងពេញលេញ ទ្រង់ជាម្ចាស់ដែលសត្វលោកទាំងឡាយសំដៅទៅរកទ្រង់ដើម្បីបំពេញតម្រូវការរបស់ពួកគេ។ ទ្រង់ជាម្ចាស់មហាឧត្តមដែលសត្វលោកទាំងឡាយត្រូវការទ្រង់។ ទ្រង់ជាអ្នកផ្តល់ចំណីអាហារដល់ពួកគេ ហើយទ្រង់គ្មានត្រូវការគេផ្តល់ចំណីអាហារឱ្យទ្រង់។ |
| السيد<br>អាស់សៃយីទ | ទ្រង់ជាម្ចាស់ដែលមានអធិបតេយ្យភាពដាច់ខាតលើសត្វលោករបស់ទ្រង់ ទ្រង់ជាម្ចាស់កម្មសិទ្ធិរបស់ពួកគេ ជាព្រះរបស់ពួកគេ។ ពួកគេជាសត្វលោក និងជាខ្ញុំបម្រើរបស់ទ្រង់។ |
| القاهر<br>អាល់ក៏ហ៊ីរ<br>القهار<br>អាល់កោះហើរ | ទ្រង់ជាម្ចាស់ដែលធ្វើឱ្យខ្ញុំបម្រើរបស់ទ្រង់ឱនលំទោនចំពោះទ្រង់ ធ្វើឱ្យសត្វលោកទាំងឡាយក្លាយជាខ្ញុំបម្រើរបស់ទ្រង់។ ទ្រង់មានអំណាចត្រួតត្រា ដែលសត្វលោកទាំងឡាយឱនលំទោនចំពោះទ្រង់ ហើយសំដៅទៅរកទ្រង់។ ពាក្យ (القهار) ជាន័យវិសេសនៃពាក្យ(القاهر)។ |
| الحق<br>អាល់ហុកក៏ | ទ្រង់គឺជាម្ចាស់ដែលគ្មានភាពមន្ទិលសង្ស័យ។ គ្មានភាពមន្ទិលសង្ស័យក្នុងឈ្មោះរបស់ទ្រង់ ស៊ីហ្វាតរបស់ទ្រង់ គ្មានសង្ស័យចំពោះអុលូហីយ៉ះរបស់ទ្រង់។ ទ្រង់ជាម្ចាស់ដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដ។ គ្មានម្ចាស់ដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដក្រៅពីទ្រង់។ |
| المبين<br>អាល់ម៉ូពៃយីន | ទ្រង់ជាម្ចាស់ដែលច្បាស់លាស់ក្នុងឯកទេវភាពរបស់ទ្រង់(វ៉ះឌានីយ៉ះ) គតិបណ្ឌិតរបស់ទ្រង់ និងក្តីមេត្តារបស់ទ្រង់។ ទ្រង់ចង្អុលបង្ហាញផ្លូវត្រូវដល់ខ្ញុំបម្រើរបស់ទ្រង់ ដើម្បីឱ្យពួកគេប្រតិបត្តិតាមទ្រង់ ហើយទ្រង់បង្ហាញផ្លូវវង្វេងដើម្បីឱ្យពួកគេប្រុងប្រយ័ត្ន។ |
| القوي<br>អាល់ក៏វីយ៍ | ទ្រង់ជាម្ចាស់ដែលមានអានុភាពខ្លាំងក្លាដាច់ខាត ព្រមជាមួយនឹងចេតនាដ៏សុក្រឹតពេញលេញរបស់ទ្រង់។ |
| المتين<br>អាល់ម៉ាទីន | ទ្រង់ខ្លាំងក្លាក្នុងអានុភាពរបស់ទ្រង់និងអំណាចរបស់ទ្រង់។ គ្មានអ្វីពិបាកចំពោះអ្វីដែលទ្រង់ធ្វើ ហើយគ្មានការនឿយហត់។ |
| الحيي<br>អាល់ហៃយីយ៍ | ទ្រង់ជាម្ចាស់ដែលមានភាពខ្មាសអៀនស័ក្តិសមនឹងព្រះកិត្តិនាមរបស់ទ្រង់និងអំណាចដ៏ថ្កុំថ្កើងរបស់ទ្រង់។ ភាពខ្មាសអៀនរបស់ទ្រង់គឺជាក្តីករុណាអំពើកុសល មហាអនុគ្រោះ និងមហាឧត្តុង្គឧត្តម។ |
| الحي<br>អាល់ហៃយ៍ | ទ្រង់ជាម្ចាស់ដែលមានជីវិតអតមៈនិងពេញលេញសុក្រឹតបំផុត។ ទ្រង់គង់នៅជាអមតៈគ្មានការចាប់ផ្តើមនឹងគ្មានទីបញ្ចប់។ រាល់ជីវិតនៃអ្វីគ្រប់យ៉ាងមកពីទ្រង់។ |





| | |
|---|---|
| القيوم<br>អាល់កុយយូម | ទ្រង់គង់ដោយព្រះអង្គឯង។ ទ្រង់មិនត្រូវការសត្វលោករបស់ទ្រង់។ ទ្រង់ធ្វើឱ្យអ្វីគ្រប់យ៉ាងដែលនៅលើមេឃនឹងនៅលើដីគង់វង្ស។ ពួកគេទាំងនោះត្រូវការចាំបាច់ចំពោះទ្រង់។ |
| الشاكر<br>អាស់ស្ទើកៀរ | ទ្រង់សរសើរចំពោះអ្នកដែលស្តាប់បង្គាប់និងប្រតិបត្តិតាមទ្រង់។ ទ្រង់តបស្នងចំពោះរាល់អំពើទាំងឡាយ សូម្បីអំពើនោះតិចតួចក៏ដោយ។ ទ្រង់ប្រទានជូនពរជ័យបន្ថែមចំពោះអ្នកដែលដឹងគុណចំពោះពរជ័យរបស់ទ្រង់នៅក្នុងលោកិយនេះ ហើយទទួលបានផលបុណ្យនៅថ្ងៃបរលោក។ |
| الشكور<br>អាស់ស្ទូកួរ | ទ្រង់បង្កើនអំពើល្អសម្រាប់អ្នកដែលធ្វើអំពើល្អបានតិចតួច។ ការដឹងគុណរបស់ទ្រង់ចំពោះខ្ញុំបម្រើទ្រង់គឺការប្រទានផលបុណ្យសម្រាប់ការដឹងគុណរបស់គេចំពោះទ្រង់ ហើយទទួលយកការប្រតិបត្តិរបស់គេ។ |
| الفتاح<br>អាល់ហ្វាតតាហ | ទ្រង់ជាម្ចាស់ដែលបើកចំហឃ្លាំងសម្បត្តិរបស់ទ្រង់ ក្តីមេត្តារបស់ទ្រង់និងវិសេសគឺរបស់ទ្រង់តាមតែទ្រង់សព្វព្រះទ័យ ស្របតាមគតិបណ្ឌិតរបស់ទ្រង់និងពុទ្ធិរបស់ទ្រង់។ |
| العليم<br>អាល់អាឡីម | ទ្រង់មានពុទ្ធិដឹងជ្រាបពីអ្វីដែលបើកចំហនិងលាក់បាំង អាថ៌កំបាំងនិងលាតត្រដាង។ ទ្រង់ដឹងពីអតីតកាល បច្ចុប្បន្នកាល និងអនាគតកាល។ គ្មានអ្វីលាក់បាំងនឹងទ្រង់ឡើយ។ |
| الحكيم<br>អាល់ហាគីម | ទ្រង់រៀបចំទុកដាក់អ្វីមួយឱ្យត្រូវតាមកន្លែងរបស់វា ការចាត់ចែងរបស់ទ្រង់គ្មានភាពខ្វះចន្លោះ និងគ្មានការភ្លាត់ភ្លាំងនោះទេ។ |
| الخبير<br>អាល់ខបៀរ | ទ្រង់ជាម្ចាស់ដែលមានពុទ្ធិដឹងពីរឿងរ៉ាវសម្ងាត់អ្វីគ្រប់យ៉ាងដូចទ្រង់ដឹងរឿងរ៉ាវបើកចំហដែរ។ |
| التواب<br>អាត់តៅវ៉ាប | ទ្រង់ជាម្ចាស់ដែលប្រទានដល់ខ្ញុំបម្រើណាដែលទ្រង់សព្វព្រះទ័យឱ្យបានសម្រេចក្នុងការតាវហ្ពាត់ ហើយទ្រង់ទទួលយកការតាវហ្ពាត់នោះពីពួកគេ។ |
| القريب<br>អាល់ករីប | ទ្រង់នៅជិតដោយពុទ្ធិចំណេះដឹងរបស់ទ្រង់ អានុភាពរបស់ទ្រង់ចំពោះសត្វលោកទូទៅ ដោយក្តីអាណិតមេត្តា និងការជួយគាំទ្ររបស់ទ្រង់ចំពោះខ្ញុំបម្រើទ្រង់ដែលមានជំនឿ។ ទោះជាយ៉ាងនេះក៏ដោយ ទ្រង់នៅលើអារ៉ស្ហរបស់ទ្រង់ ហ្សាតរបស់ទ្រង់មិននៅលាយឡំជាមួយនឹងសត្វលោកនោះទេ។ |
| المجيب<br>អាល់ម៉ូជីប | ទ្រង់ជាម្ចាស់ដែលឆ្លើយតបនឹងការទូអា និងការបួងសួងសុំ ស្របតាមពុទ្ធិចំណេះដឹង និងគតិបណ្ឌិតរបស់ទ្រង់។ |
| الودود | ទ្រង់ស្រឡាញ់អាវលីយ៉ាករបស់ទ្រង់ ស្រឡាញ់ពួកគេដោយការអភ័យ |

| | |
|---|---|
| អាល់វ៉ាទូទ | ទោស និងផ្តល់នៀកម៉ាត់។ ទ្រង់សព្វព្រះទ័យចំពោះពួកគេ ទ្រង់ទទួលយកអំពើល្អរបស់ពួកគេ ហើយនៅលើផែនដីនេះទ្រង់ចូលចិត្តពួកគេ។ |
| الولي<br>អាល់វ៉ាលី | ទ្រង់ជាអ្នកគ្រប់គ្រងលើកិច្ចការសត្វលោកទាំងឡាយ និងការចាត់ចែងអំណាច ហើយជាអ្នកជួយគាំទ្រដល់អាវលីយ៉ាករបស់ទ្រង់។ |
| الحميد<br>អាល់ហាមីទ | ទ្រង់ជាម្ចាស់ដែលត្រូវគេសរសើរក្នុងព្រះនាមរបស់ទ្រង់ ស៊ីហ្វាតរបស់ទ្រង់ និងទង្វើរបស់ទ្រង់។ ទ្រង់ជាម្ចាស់ដែលត្រូវគេសរសើរទាំងក្នុងពេលសុខសប្បាយ និងពេលកើតទុក្ខ ទាំងក្នុងពេលមានគ្រោះថ្នាក់ និងពេលរួចផុតភ័យ។ ទ្រង់ស័ក្តិសមបំផុតចំពោះសេចក្តីសរសើរទាំងឡាយ។ ពីព្រោះទ្រង់មានលក្ខណសម្បត្តិដែលល្អសុក្រឹតពេញលេញបំផុត។ |
| المولى<br>អាល់ម៉ៅឡើ | ទ្រង់ជាម្ចាស់ ជាស្តេច ជាអ្នកគាំទ្រ និងជួយដល់អាវលីយ៉ាករបស់ទ្រង់។ |
| النصير<br>អាន់ណាស៊្វៀរ | ទ្រង់ជាអ្នកជួយគាំទ្រដល់អ្នកណាដែលទ្រង់សព្វព្រះទ័យ។ គ្មានអ្នកណាអាចឈ្នះបុគ្គលណាដែលទ្រង់ជួយគាំទ្រ។ ម្យ៉ាងទៀត គ្មានអ្នកណាជួយសង្គ្រោះចំពោះអ្នកដែលទ្រង់បោះបង់គេចោល។ |
| الحفيظ<br>អាល់ហាហ្វីហ្ស | ទ្រង់ជាអ្នករក្សានិងការពារខ្ញុំបម្រើរបស់ទ្រង់ ដែលមានជំនឿនិងអំពើល្អរបស់ពួកគេដោយក្តីមេត្តារបស់ទ្រង់។ ទ្រង់រក្សានិងការពារសត្វលោកទាំងឡាយដោយអានុភាពរបស់ទ្រង់។ |
| المجيد<br>អាល់ម៉ាជីទ | ទ្រង់ជាម្ចាស់មហាមោទនៈ មហាករុណា មហាថ្លៃថ្លា និងមហាខ្ពង់ខ្ពស់នៅលើមេឃនិងនៅលើផែនដី។ |
| الشهيد<br>អាស់ស្ហីហ៊ុទ | ទ្រង់ជាម្ចាស់ដែលឃ្លាំមើលសត្វលោករបស់ទ្រង់។ ទ្រង់ធ្វើសាក្សីលើព្រះអង្គឯងពីភាពតែមួយរបស់ទ្រង់ និងការគ្រប់គ្រងដោយយុត្តិធម៌។ ទ្រង់ធ្វើសាក្សីលើសច្ចភាពរបស់ពួកអ្នកមានជំនឿ នៅពេលណាពួកគេជឿចំពោះទ្រង់តែមួយ។ ហើយទ្រង់ជាសាក្សីចំពោះពួកអ្នកនាំសាររបស់ទ្រង់និងម៉ាឡាអ៊ីគាត់របស់ទ្រង់។ |
| المقدم<br>អាល់មូ៉ក៏ដទីម | ទ្រង់ជាម្ចាស់ផ្តល់អាទិភាពឱ្យអ្វីនីមួយៗ ហើយរៀបចំទុកដាក់វាឱ្យត្រូវតាមកន្លែងរបស់វាស្របតាមព្រះចេតនា និងគតិបណ្ឌិតរបស់ទ្រង់។ ទ្រង់ផ្តល់អាទិភាពមុនក្រោយចំពោះសត្វលោករបស់ទ្រង់ស្របតាមពុទ្ធិរបស់ទ្រង់ និងគុណសម្បត្តិរបស់ទ្រង់។ |
| المؤخر<br>អាល់មូ៉អាខឺរ | ទ្រង់ជាម្ចាស់ដែលរៀបចំទុកដាក់អ្វីនីមួយៗឱ្យត្រូវតាមឋានៈរបស់វា ទ្រង់ផ្តើមអ្វីមួយ និងពន្យារអ្វីមួយតាមតែទ្រង់សព្វព្រះទ័យ។ ទ្រង់ |





| | |
|---|---|
| | ពន្យារការដាក់ទារុណកម្មលើខ្ញុំបម្រើរបស់ទ្រង់ សង្ឃឹមថាពួកគេតាវហ្គាត់ និងវិលត្រឡប់ទៅរកទ្រង់។ |
| المسعر<br>អាល់មូ៉ស័កអ៊ីរ | ទ្រង់ដំឡើងថ្លៃនៃអ្វីគ្រប់យ៉ាង ឋានៈរបស់វា ឥទ្ធិពលរបស់វា ឬបន្ថយបរិមាណរបស់វា ធ្វើឱ្យវាឡើងថ្លៃ ឬត្រូវចុះថោកអាស្រ័យតាមគតិបណ្ឌិតរបស់ទ្រង់និងពុទ្ធិចំណេះដឹងរបស់ទ្រង់។ |
| القابض<br>អាល់ក៏ពីទ<br>الباسط<br>អាល់ពើស៊ីត | ទ្រង់ជាម្ចាស់ដែលដកហូតជីវិត និងរារាំងរិសគីពីអ្នកណាដែលទ្រង់មានចេតនា ស្របតាមគតិបណ្ឌិតនិងអានុភាពរបស់ទ្រង់។ ទ្រង់ជាម្ចាស់បើកទូលាយរិសគីចំពោះខ្ញុំបម្រើរបស់ទ្រង់ដោយក្តីករុណា និងក្តីមេត្តារបស់ទ្រង់។ ទ្រង់សាកល្បងពួកគេនឹងអ្វីទាំងអស់នោះស្របតាមគតិបណ្ឌិតរបស់ទ្រង់។ ទ្រង់បើកដៃទទួលយកការតាវហ្គាត់ចំពោះអ្នកដែលបានប្រព្រឹត្តអំពើអាក្រក់។ |
| المعطي<br>អាល់ម៉ុកទី | ទ្រង់ផ្តល់ឱ្យខ្ញុំបម្រើណាដែលទ្រង់សព្វព្រះទ័យនូវអ្វីដែលទ្រង់ចង់ឱ្យនៃឃ្លាំងសម្បត្តិរបស់ទ្រង់។ សម្រាប់ពួកអាវលីយ៉ាករបស់ទ្រង់មានចំណែកធំក្នុងការប្រទានរបស់ទ្រង់នេះ។ ទ្រង់ជាអ្នកផ្តល់អ្វីគ្រប់យ៉ាងឱ្យមានកំណើតរបស់វា និងរូបសម្បត្តិរបស់វា។ |
| الديان<br>អាទទៃយ៉ាន | ទ្រង់ជាម្ចាស់ដែលសត្វលោកទាំងឡាយស្តាប់បង្គាប់ទ្រង់ និងឱនលំទោនចំពោះទ្រង់។ ទ្រង់ជាអ្នកតបស្នងចំពោះអ្វីដែលពួកគេបានធ្វើ។ បើជាអំពើល្អទ្រង់បង្កើនទ្វេដង បើជាអំពើអាក្រក់ទ្រង់ដាក់ទារុណកម្មលើវាឬអត់ឱន។ |
| المنان<br>អាល់ម៉ាន់ណាន | ទ្រង់ប្រទានឱ្យច្រើនបំផុត ទ្រង់មហាប្រទានពរជ័យ មហាកុសលចំពោះសត្វលោករបស់ទ្រង់។ |
| الرازق<br>អារ៉ោហ្ស៊ីក | ទ្រង់ជាម្ចាស់ដែលផ្តល់រិសគីដល់សត្វលោកទាំងមូល។ ទ្រង់បានកំណត់រិសគីរបស់ពួកគេមុននឹងទ្រង់បង្កើតសាកលលោកទាំងមូល។ ម្យ៉ាងទៀតទ្រង់ធានាផ្តល់ឱ្យគ្រប់ចំនួន បើទោះយឺតយ៉ាវក៏ដោយ។ |
| الرزاق<br>អារ៉ោហ្ស៊ីក | ជាឈ្មោះបញ្ជាក់ពីការផ្តល់រិសគីដ៏ច្រើនសន្ធឹកសន្ធាប់ដល់សត្វលោករបស់ទ្រង់។ ទ្រង់ជាម្ចាស់ដ៏មហាពិសិដ្ឋ។ទ្រង់ផ្តល់រិសគីដល់ពួកគេមុននឹងពួកគេបួងសួងសុំទ្រង់។ មិនតែប៉ុណ្ណោះ សូម្បីតែពួកគេល្មើសនឹងទ្រង់ក៏ទ្រង់ផ្តល់រិសគីឱ្យពួកគេដែរ។ |
| الوكيل<br>អាល់វ៉ាកីល | ទ្រង់ជាម្ចាស់ទទួលខុសត្រូវចំពោះសាកលលោក ហើយទ្រង់ទទួលខុសត្រូវបង្កើតពួកគេនិងការចាត់ចែង។ ទ្រង់ជាអ្នកទទួលខុសត្រូវចំពោះសត្វលោកទាំងការបង្កើតនិងកំណើនរបស់ពួកគេ។ ទ្រង់ជាអ្នកទទួលខុសត្រូវចំពោះពួកអ្នកមានជំនឿដែលប្រគល់កិច្ចការរបស់ |

| | |
|---|---|
| | ពួកគេចំពោះ អល់ឡោះ មុននឹងពួកគេធ្វើកិច្ចការនោះ។ ពួកគេសុំជំនួយពីទ្រង់ពេលដែលពួកគេកំពុងស្វែងរក។ ពួកគេដឹងគុណចំពោះទ្រង់បន្ទាប់ពីទ្រង់ធ្វើឱ្យពួកគេទទួលបានសម្រេចជោគជ័យ។ ពួកគេពេញចិត្តនឹងអ្វីដែលទ្រង់បានចែកជូនពួកគេបន្ទាប់ពីទ្រង់សាកល្បងពួកគេ។ |
| الرقيب<br>អាររ៉ក៏ីប | ទ្រង់ទតឃើញទាំងអស់សត្វលោករបស់ទ្រង់។ ទ្រង់គណនាទុកនូវទង្វើរបស់ពួកគេ។ គ្មានអ្វីរបូតចេញពីទ្រង់សូម្បីមួយពព្រិចភ្នែកឬគិតអ្វីបន្តិច។ |
| المحسن<br>អាល់ម៉ោះស៊ីន | ទ្រង់មានសោភ័ណភាពពេញលេញក្នុងហ្សាតរបស់ទ្រង់ ឈ្មោះរបស់ទ្រង់ ស៊ីហ្វាតរបស់ទ្រង់ និងទង្វើរបស់ទ្រង់ ទ្រង់បង្កើតអ្វីគ្រប់យ៉ាងល្អសុក្រឹតឥតខ្ចោះ ហើយទ្រង់មានព្រះទ័យកុសលធម៌ចំពោះសត្វលោករបស់ទ្រង់។ |
| الحسيب<br>អាល់ហាស៊ីប | ទ្រង់គ្រប់គ្រាន់សម្រាប់ខ្ញុំបម្រើរបស់ទ្រង់ អ្វីទាំងអស់ដែលពួកគេគិតខ្វល់ខ្វាយពីបញ្ហាសាសនារបស់ពួកគេ និងបញ្ហាលោកិយរបស់ពួកគេ។ សម្រាប់ពួកអ្នកមានជំនឿមានចំណែកធំបំផុតក្នុងភាពគ្រប់គ្រាន់នេះ។ ទ្រង់ជាម្ចាស់មហាពិសិដ្ឋ។ ទ្រង់ទូទាត់ឱ្យពួកគេនូវអ្វីដែលពួកគេធ្វើនៅក្នុងលោកិយនេះ។ |
| الشافي<br>អាស់ស្ហ៊ីហ្វី | ទ្រង់ជាម្ចាស់ដែលធ្វើឱ្យរូបកាយនិងចិត្តជាពីជំងឺ។ ក្នុងដៃខ្ញុំបម្រើរបស់ទ្រង់គ្មានអ្វីក្រៅពីថ្នាំដែល អល់ឡោះ បានសម្រួលវាសម្រាប់ពួកគេ។ ឯចំណែកការជាពីជំងឺគឺឋិតក្នុងកណ្តាប់ដៃរបស់ទ្រង់តែមួយគត់។ |
| الرفيق<br>អាររ៉ហ្វីក | ទ្រង់ជាម្ចាស់ដ៏មហាទន់ភ្លន់ចំពោះសត្វលោករាល់ទង្វើរបស់ទ្រង់។ ទ្រង់ជាម្ចាស់ដែលបង្កើតនិងដាក់បញ្ញាដោយសន្សឹមៗនិងជាលំដាប់។ ទ្រង់ប្រាស្រ័យជាមួយនឹងសត្វលោកទាំងឡាយដោយថ្នមៗនិងទន់ភ្លន់។ ទ្រង់មិនដាក់បន្ទុកអ្វីដែលលើសពីសមត្ថភាពរបស់ពួកគេ។ ទ្រង់សព្វព្រះទ័យចំពោះខ្ញុំបម្រើរបស់ទ្រង់ណាដែលទន់ភ្លន់ និងសុភាពរាបសា។ |
| المقيت<br>អាល់ម៉ូគីត | ទ្រង់ជាម្ចាស់ដែលបានបង្កើតស្បៀងអាហារនិងវិសគី ហើយទ្រង់ជានាជូនវាឱ្យដល់សត្វលោករបស់ទ្រង់។ ទ្រង់ជាអ្នករក្សាការពារវា និងរក្សាការពាររាល់ទង្វើរបស់ខ្ញុំបម្រើទ្រង់ដោយគ្មានបាត់បង់។ |
| الطيب<br>អាត់តុយយីប | ទ្រង់មហាស្អាតស្អំ ទ្រង់មហាសុវត្ថិភាពរួចផុតពីរាល់ភាពអាប់ឱននិងភាពខ្វះចន្លោះ។ ទ្រង់មានសោភ័ណភាពល្អសុក្រឹតឥតខ្ចោះ។ ទ្រង់ធ្វើល្អបំផុតចំពោះសត្វលោករបស់ទ្រង់។ ទ្រង់មិនទទួលយករាល់អំពើនិងការដាក់ទានទាំងឡាយលើកលែងតែអ្វីដែលហាឡាល់ |

| | |
|---|---|
| | និងស្អាតស្អំ ហើយជ្រះថ្លាចំពោះទ្រង់។ |
| الحكم<br>អាល់ហាកាំម | ទ្រង់ជាម្ចាស់កាត់ក្តីរវាងសត្វលោករបស់ទ្រង់ដោយយុត្តិធម៌។ ទ្រង់មិនរំលោភបំពានដោយអយុត្តិធម៌ទៅលើនរណាម្នាក់។ ទ្រង់បានបញ្ចុះគម្ពីរដ៏ថ្លៃថ្លាដើម្បីជាតុលាការកាត់ក្តីរវាងមនុស្សលោក។ |
| البر<br>អាល់ពើរ៍ | ទ្រង់មហាទូលាយក្នុងការធ្វើល្អចំពោះសត្វលោករបស់ទ្រង់ ទ្រង់ប្រទានឱ្យ ហើយគ្មាននរណាម្នាក់រាប់អស់នូវនៀកម៉ាត់របស់ទ្រង់។ ទ្រង់ស្មោះត្រង់ចំពោះការសន្យារបស់ទ្រង់។ ទ្រង់លើកលែងនិងអត់ឱនចំពោះខ្ញុំបម្រើរបស់ទ្រង់។ ទ្រង់ជួយគាំទ្រនិងការពារពួកគេ។ ទ្រង់ទទួលយកអំពើល្អដ៏តិចតួចរបស់ពួកគេ ហើយបណ្តុះឱ្យអំពើល្អនោះរីកចម្រើន។ |
| السبوح<br>អាស់សើពួស | ទ្រង់មហាស្អាតស្អំពីរាល់ក្តីអាម៉ាស់និងភាពខ្វះខាតទាំងឡាយ ពីព្រោះទ្រង់ជាម្ចាស់ដែលមានលក្ខណសម្បត្តិពេញលេញ មហាសោភ័ណ ល្អស្រស់បំផុត។ |
| الوارث<br>អាល់វ៉ារីស | ទ្រង់ជាម្ចាស់គង់នៅជាអមតៈ បន្ទាប់ពីសត្វលោកទាំងឡាយបានវិនាស។ អ្វីគ្រប់យ៉ាងវិលទៅរកទ្រង់ក្រោយពេលម្ចាស់កម្មសិទ្ធិរបស់វាត្រូវវិនាសអស់។ អ្វីទាំងអស់ដែលនៅក្នុងដៃរបស់យើងគឺជាបញ្ញើ ហើយនៅថ្ងៃណាមួយវានឹងវិលត្រឡប់ទៅរកទ្រង់វិញជាម្ចាស់កម្មសិទ្ធិដ៏ពិតប្រាកដ ។ |
| الإله<br>អាល់អ៊ីឡើហ៍ | ទ្រង់ជាម្ចាស់ដែលត្រូវគេគោរពសក្ការៈយ៉ាងពិតប្រាកដ ទ្រង់ស័ក្តិសមនឹងគេគោរពសក្ការៈ គ្មានអ្នកផ្សេងក្រៅពីទ្រង់ឡើយ។ |

**១៣-តើរវាងឈ្មោះនិងលក្ខណសម្បត្តិរបស់ អល់ឡោះ មានភាពខុសគ្នាដូចម្តេច?** គេអនុញ្ញាតឱ្យយើងស្បថឬសុំអ្វីម្យ៉ាងតាមរយៈបណ្តាឈ្មោះនិងលក្ខណៈរបស់ អល់ឡោះ បាន។ ក៏ប៉ុន្តែរវាងឈ្មោះ និងលក្ខណៈរបស់ទ្រង់មានចំណុចផ្ទុយគ្នាខ្លះៗ។ អ្វីដែលសំខាន់គឺទី១ គេអនុញ្ញាតឱ្យយកឈ្មោះហៅមនុស្សដោយការដាក់ពាក្យ (عبد) នៅពីមុខ ហើយទូអាតាមរយៈឈ្មោះរបស់ទ្រង់ក្រៅពីស៊ីហ្វាតរបស់ទ្រង់។ ការហៅឈ្មោះដូចជាយើងហៅថា (عبدالكريم) តែបើហៅឈ្មោះថា (عبدالكرم) វិញគេមិនអនុញ្ញាតនោះទេ។ ទូអាដូចជា (يا كريم) ហើយគេមិនអនុញ្ញាតទូអាថា (يا كرم الله) នោះទេ។ ទី២ ឈ្មោះរបស់ អល់ឡោះ កម្លាយចេញពីគុណនាមដូចជាពាក្យ (الرحمن) កម្លាយចេញពីគុណនាម (الرحمة)។ រីឯស៊ីហ្វាតរបស់ទ្រង់មិនកម្លាយចេញពីឈ្មោះដែលគ្មាននៅក្នុងរីវ៉ាយ៉ាត់ដូចជាស៊ីហ្វាត (الاستواء) មិនមែនកម្លាយចេញពីពាក្យ (المستوي) នោះទេ។ ទី៣ អំពើរបស់



អល់ឡោះ ក៏មិនកម្លាយចេញពីនាមដែលគ្មានក្នុងវិវាំយ៉ាត់នោះដែរ។ អំពី អំពើរបស់ អល់ឡោះ (الغضب) មានន័យថាខឹង។ គេមិនអាចនិយាយថាអំពីឈ្មោះរបស់ អល់ឡោះ (الغاضب) នោះទេ។ ឯចំណែកស៊ីហ្វាតរបស់ទ្រង់គឺកម្លាយចេញទង្វើរបស់ទ្រង់។ ដូចជាស៊ីហ្វាត (الغضب) ខឹង យើងទទួលស្គាល់ថាវាជាស៊ីហ្វាតរបស់ អល់ឡោះ ពីព្រោះ (الغضب) ជាអំពើរបស់ អល់ឡោះ។

**១៤- តើជំនឿលើម៉ាឡាអ៊ីកាត់(ទេវតា)មានអត្ថន័យដូចម្តេច?** ជំនឿលើ ម៉ាឡាអ៊ីកាត់ (ទេវតា) គឺការទទួលស្គាល់យ៉ាងប្រាកដថាមាន ម៉ាឡាអ៊ីកាត់ (ទេវតា) ហើយពិតណាស់ អល់ឡោះ បង្កើតពួកគេដើម្បីគោរពសក្ការៈចំពោះទ្រង់និងប្រតិបត្តិតាមបញ្ជារបស់ទ្រង់។ អល់ឡោះ បានមានបន្ទូលថា៖ ﴿عِبَادٌ مُّكۡرَمُونَ ۝٢٦ لَا يَسۡبِقُونَهُۥ بِٱلۡقَوۡلِ وَهُم بِأَمۡرِهِۦ يَعۡمَلُونَ﴾ មានន័យថា៖ ពួកគេ (ម៉ាឡាអ៊ីកាត់) គឺជាខ្ញុំរបស់ អល់ឡោះ ដែលត្រូវបានគេលើកតម្កើង។ ពួកគេ (ម៉ាឡាអ៊ីកាត់) មិនហ៊ានផ្តើមសម្តីមុនទ្រង់ឡើយ ហើយពួកគេប្រតិបត្តិតាមការបញ្ជារបស់ទ្រង់។(អាល់អាំពីយ៉ាក : ២៦-២៧)

**ការមានជំនឿលើ ម៉ាឡាអ៊ីកាត់ (ទេវតា) រួមផ្សំនូវប្រការមួយចំនួនដូចជា**

១- ជឿជាក់ថាពួកគេពិតជាមាន។ ២- ជឿចំពោះ ម៉ាឡាអ៊ីកាត់ ណាដែលយើងបានស្គាល់ឈ្មោះរបស់គេក្នុងនោះមាន ជីព្រីល ជាដើម។

៣-ជឿលើអ្វីដែលយើងបានដឹងអំពីលក្ខណៈរបស់ពួកគេដូចជាពួកគេមានមាឌធំមហិមា។

៤-ជឿលើអ្វីដែលយើងបានដឹងអំពីតួនាទីរបស់ពួកគេ ដែលជាមុខងារដោយឡែកសម្រាប់ពួកគេដូចជា ម៉ាឡាកិលម៉ោត ជាដើម។

**១៥- តើគួរអានគឺជាអ្វី?** អាល់គួរអាន គឺជាបន្ទូលរបស់ អល់ឡោះ ជាម្ចាស់ដែលគេយកមកសូត្រនៅក្នុងការគោរពសក្ការៈ ហើយការសូត្រវាគឺជា អ៊ីហ្បាហ្វាត់ ។ អាល់គួរអានមកពី អល់ឡោះ ហើយវានឹងត្រឡប់ទៅរកទ្រង់វិញ។ អល់ឡោះ បានបន្ទូលយ៉ាងពិតប្រាកដ ដោយមានតួអក្សរនិងសំឡេង។ ជីព្រីលបានស្តាប់ឮពីទ្រង់ ហើយក៏បាននាំមកប្រាប់ណាពី ម៉ូហាំម៉ាត់ ។ គម្ពីរៗដែលមកពីលើមេឃទាំងអស់គឺសុទ្ធតែជាបន្ទូលរបស់ អល់ឡោះ។

**១៦- តើយើងទទួលយកតែអាល់គួរអានដោយមិនចាំបាច់ស៊ុណ្ណះរបស់ណាពី ម៉ូហាំម៉ាត់បានទេ?** យើងមិនអាចធ្វើដូច្នេះជាដាច់ខាត។ អល់ឡោះ បានប្រើឱ្យទទួលយកស៊ុណ្ណះ តាមរយៈបន្ទូលរបស់ទ្រង់៖ ﴿وَمَآ ءَاتَىٰكُمُ ٱلرَّسُولُ فَخُذُوهُ وَمَا نَهَىٰكُمۡ عَنۡهُ فَٱنتَهُواْ﴾ មានន័យថា៖ ហើយអ្វីដែលអ្នកនាំសារបានផ្តល់ឱ្យពួកអ្នក ចូរពួកអ្នកទទួលយកវាចុះ។ ចំណែកអ្វីដែលគាត់បានហាមឃាត់ពួកអ្នកអំពីវា ចូរពួកអ្នកបោះបង់ចោលចុះ។

(អាល់ហាស្ហ័រ : ៧)




ស៊ុណ្ណះ បាននាំមកនូវការបកស្រាយគម្ពីរអាល់គួរអាន ហើយក៏គ្មានការយល់ដឹងក្បោះក្បាយអំពីសាសនាដែរ ក្រៅពីតាមរយៈ ស៊ុណ្ណះ នេះដូចជាការ សឡាត ជាដើម។ ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថាៈ មានន័យថាៈ **ចូរប្រុងប្រយ័ត្ន! ពិតណាស់ ខ្ញុំបានទទួលគម្ពីរអាល់គួរអាននិងអ្វីដែលដូចគម្ពីរអាល់គួរអាន។ ចូរប្រុងប្រយ័ត្ន! ពិតណាស់ មានបុរសខ្ជិលម្នាក់អង្គុយតែនៅលើសាឡុងរបស់គេស្ទើរតែរាល់ថ្ងៃ ហើយនិយាយថាពួកអ្នកត្រូវប្រកាន់ខ្ជាប់នឹងគម្ពីរអាល់គួរអាន។ បើសិនជាអ្វីដែលពួកអ្នកបានឃើញក្នុងគម្ពីរនេះនូវអ្វីដែលហាឡាល់ ចូរពួកអ្នកគិតថាវាហាឡាល់ ហើយអ្វីដែលពួកអ្នកមើលឃើញក្នុងគម្ពីរនេះនូវអ្វីដែលហារ៉ាម ចូរពួកអ្នកគិតថាវាហារ៉ាមចុះ។** (អាពូទើវ៉ូទ)

**១៧-តើការជឿលើបណ្តារ៉ស៊ូលមានអត្ថន័យដូចម្តេច?** វាគឺជាការជឿជាក់យ៉ាងប្រាកដថា អល់ឡោះ បានតែងតាំងលើ អ៊ូម៉ាត់ នីមួយៗនូវរ៉ស៊ូលម្នាក់អំពីពួកគេ ដើម្បីអំពាវនាវពួកគេទៅរកការគោរពសក្ការៈចំពោះ អល់ឡោះ តែមួយ ហើយប្រឆាំងនឹងអ្វីដែលត្រូវបានគេគោរពសក្ការៈផ្សេងពីទ្រង់។ ពិតណាស់ រ៉ស៊ូលទាំងអស់គឺជាអ្នកដែលស្មោះត្រង់ ជាអ្នកដែលត្រូវបានគេជឿទុកចិត្ត ឈ្លាសវៃថ្លៃថ្នូរ ប្រតិបត្តិយ៉ាងខ្ជាប់ខ្ជួន កោតខ្លាច ទៀងត្រង់ អ្នកចង្អុលបង្ហាញ និងទទួលសេចក្តីចង្អុលបង្ហាញ។ ពួកគេធ្វើការផ្តល់ឬផ្សព្វផ្សាយសាររបស់ពួកគេ ហើយពួកគេគឺជាអ្នកកើតមកក្នុងកំណើតដ៏ល្អប្រពៃបំផុត។ ពួកគេជ្រះស្អាតពីប្រការ ស្ទីរិកជាមួយនឹង អល់ឡោះ តាំងពីកំណើតរហូតដល់ពួកគេអស់ជីវិត។

**១៨- តើប្រភេទនៃការជួយអន្តរាគមន៍(ស្ហាហ្វាអះ)នៅថ្ងៃបរលោកមានអ្វីខ្លះ?**
ការអន្តរាគមមានច្រើនប្រភេទ។ សំខាន់ជាងគេគឺ

**ការអន្តរាគមន៍ធំ** វាជាអន្តរាគមន៍នៅកន្លែងប្រមូលផ្តុំនាថ្ងៃបរលោក ក្រោយពេលមនុស្សបានឈរអស់រយៈពេល៥០ពាន់ឆ្នាំ ដើម្បីរង់ចាំការកាត់ក្តីរវាងពួកគេ។ ណាពី ម៉ូហាំម៉ាត់ បានសុំអន្តរាគមន៍ពីម្ចាស់របស់លោកដោយសំណូមពរចំពោះទ្រង់ឱ្យកាត់ក្តីរវាងមនុស្ស។ នេះជាការអន្តរាគមពិសេសសម្រាប់ណាពីយើង ម៉ូហាំម៉ាត់ ហើយនេះក៏ជាឋានៈមួយដែលត្រូវបានគេសរសើរនិងបានសន្យាសម្រាប់រូបលោក។

**ទីពីរ** អន្តរាគមន៍ក្នុងការបើកទ្វារឋានសួគ៌ : មនុស្សដំបូងដែលត្រូវបានគេបើកទ្វារឋានសួគ៌ឱ្យមុនគេគឺណាពីយើង ម៉ូហាំម៉ាត់ ហើយអ្នកដែលត្រូវចូលឋានសួគ៌មុនគេក្នុងចំណោម អ៊ូម៉ាត់ ទាំងឡាយគឺ អ៊ូម៉ាត់ របស់លោក។

**ទីបី** អន្តរាគមន៍ចំពោះក្រុមដែលត្រូវចុះឋាននរក ដើម្បីកុំឱ្យពួកគេចុះនរក។

**ទីបួន** អន្តរាគមន៍ចំពោះអ្នកដែលចូលឋាននរកដោយសារបទល្មើសតែមួយមុខ ដើម្បីឱ្យបានចេញពីនរក។





**ទីប្រាំ** អន្តរាគមន៍ក្នុងការលើកឋានៈដល់ក្រុមដែលនៅក្នុងឋានសួគ៌។
**ទីប្រាំមួយ** អន្តរាគមន៍ចំពោះក្រុមដែលចូលឋានសួគ៌ដោយគ្មានការជំនុំជម្រះ។
**ទីប្រាំពីរ** អន្តរាគមន៍ក្នុងការសម្រាលទារុណកម្មចំពោះអ្នក កាហ្វៀរ មួយចំនួន ហើយនេះគឺជាការអន្តរាគមពិសេសសម្រាប់ណាពីយើង មូហាំម៉ាត់ ចំពោះ អាហ្ពូតឡឹប ដែលជាឪពុកមារបស់លោក ដើម្បីបន្ធូរបន្ថយទារុណកម្មដល់គាត់។
**ទីប្រាំបី** ដោយក្ដីមេត្តារបស់ អល់ឡោះ ទ្រង់នឹងបញ្ចេញក្រុមដែលបានស្លាប់ដោយមាន តៅហេទ អំពីឋាននរក ដែលការអន្តរាគមនេះគ្មាននរណាម្នាក់អាចជួយដល់ពួកគេបានក្រៅពី អល់ឡោះ
ហើយទ្រង់នឹងបញ្ចូលពួកគេទៅក្នុងឋានសួគ៌ដោយក្តីអាណិតស្រឡាញ់របស់ទ្រង់។

**១៩-តើយើងអាចសុំជំនួយឬសុំការអន្តរាគមពីអ្នកដែលមានជីវិតបានដែរទេ?**

ពិតជាអាចសុំបាន។ ច្បាប់ឥស្លាមបានជំរុញឱ្យធ្វើការជួយដល់អ្នកដទៃដោយ អល់ឡោះ បានមានបន្ទូលថា៖ ﴿وَتَعَاوَنُوا۟ عَلَى ٱلْبِرِّ وَٱلتَّقْوَىٰ﴾ មានន័យថា **ចូរពួកអ្នកជួយគ្នាក្នុងប្រការល្អនិងការកោតខ្លាចចំពោះ អល់ឡោះ**។(អាល់ម៉ាអ៊ីឌះ:២)
រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ការពិត អល់ឡោះជួយដល់ខ្ញុំបម្រើរបស់ទ្រង់ណាដែលចេះជួយដល់បងប្អូនរបស់គេ**។(មូស្លីម)
ចំណែកឯការអន្តរាគមវិញ គឺភាពវិសេសវិសាលរបស់វាខ្ពង់ខ្ពស់ដែលមានន័យថាជាអ្នកសម្រួលឬជ្រោមជ្រែង។ ដោយ អល់ឡោះ បានមានបន្ទូលថា៖
﴿مَّن يَشْفَعْ شَفَـٰعَةً حَسَنَةً يَكُن لَّهُۥ نَصِيبٌ مِّنْهَا﴾មានន័យថា៖**ជនដែលបានជួយអន្តរាគមក្នុងអំពើល្អណាមួយ គេនឹងទទួលបានផលបុណ្យអំពីរឿងដែលគេបានអន្តរាគមនោះដែរ**។ (អាន់នីសាក:៨៥)
ហើយរ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ចូរពួកអ្នកជួយអន្តរាគមគ្នា ពួកអ្នកនឹងទទួលបានផលបុណ្យ**។(អាល់ពូខរី)

**ការអន្តរាគមនេះមានលក្ខខណ្ឌដូចជា**

១- ការសុំជំនួយឬការសុំអន្តរាគមន៍នេះ ចាំបាច់ត្រូវសុំពីអ្នកដែលនៅរស់ ហើយការសុំពីអ្នកដែលស្លាប់នោះ គេឱ្យឈ្មោះថា ទូអា (ការបួងសួង)។ ចំណែកអ្នកដែលបានស្លាប់ហើយមិនអាចស្តាប់ឮអ្នកដែលបានបួងសួងពីគេទេ។ អល់ឡោះ បានមានបន្ទូលថា៖ ﴿إِن تَدْعُوهُمْ لَا يَسْمَعُوا۟ دُعَآءَكُمْ وَلَوْ سَمِعُوا۟ مَا ٱسْتَجَابُوا۟ لَكُمْ﴾ មានន័យថា៖ **ប្រសិនបើពួកអ្នកបួងសួងពីពួកគេ(អ្នកស្លាប់)នោះ គឺពួកគេមិនអាចស្តាប់ឮការបួងសួងរបស់ពួកអ្នកបានទេ។ ទោះបីជាពួកគេស្តាប់ឮក៏ដោយ ក៏ពួកគេមិនអាចឆ្លើយតបនឹងពួកអ្នកបានដែរ**។ (ហ្វាតៀរ:១៤)
តើឱ្យអ្នកដែលបានស្លាប់ទៅហើយនោះ ត្រូវគេបួងសួងសុំបានដូចម្តេចទៅ! តាម




ពិតពួកគេវិញទេដែលជាអ្នកត្រូវការការបួងសួងពីអ្នកដែលនៅរស់ទៅឱ្យពួកគេ។ វាត្រូវបានកាត់ផ្ដាច់អំពី អាម៉ាល់ របស់គេតាមរយៈការស្លាប់របស់គេ លើកលែងតែតាមរយៈអ្វីដែលអាចទៅដល់គេអំពីផលបុណ្យនៃការ ទូអា ឬផ្សេងៗទៀត។ រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **កាលណាកូនចៅ អាហ្ទាំ បានស្លាប់ គឺត្រូវបានកាត់ផ្ដាច់ទាំងអស់អំពី អាម៉ាល់ របស់គេលើកលែងតែបីប្រការប៉ុណ្ណោះ គឺទានដែលគេបានបរិច្ចាគ ហើយចំណេះដឹងដែលផ្ដល់ផលប្រយោជន៍ និងកូនកត្តញ្ញូ ទូអា ដល់គេ។** (មូស្លីម)

២- ត្រូវយល់ពីអ្វីដែលគេកំពុងតែសុំ។ ៣- អ្វីដែលគេសុំគឺអាចនឹងមាន។
៤-ប្រការដែលគេសុំគឺមានលទ្ធភាពអាចធ្វើទៅបាន។
៥- រឿងដែលគេសុំគឺជារឿងលោកិយ។
៦- ប្រការដែលគេសុំជាប្រការដែលច្បាប់អនុញ្ញាត ដែលមិនបង្កឱ្យមានគ្រោះថ្នាក់។

**២០-តើការសុំមានប៉ុន្មានផ្នែក?** ការសុំមានពីរផ្នែកគឺ ទីមួយ ត្រូវបានច្បាប់អនុញ្ញាត ហើយវាមានបីប្រភេទគឺ ១- សុំចំពោះ អល់ឡោះ តាមរយៈឈ្មោះ និងលក្ខណសម្បត្តិទាំងឡាយរបស់ទ្រង់។ ២- សុំចំពោះ អល់ឡោះ តាមរយៈទង្វើដែលល្អៗដូចក្នុងរឿងបុរសបីនាក់ដែលនៅក្នុងរូងភ្នំ។ ៣- សុំចំពោះ អល់ឡោះ តាមរយៈជនឥស្លាមស្មោះសណាម្នាក់ដែលនៅរស់ ហើយសង្ឃឹមថា អល់ឡោះ ទទួលនូវការ ទូអា របស់គេ។ ទីពីរ ត្រូវបានច្បាប់ហាមឃាត់(ហារ៉ាំ) ហើយវាមានពីរប្រភេទគឺ

១-សុំទៅចំពោះ អល់ឡោះ តាមរយៈអំណាចរបស់ណាពីឬមេដឹកនាំណាម្នាក់។ ឧទាហរណ៍ថា : ឱ អល់ឡោះ ! ខ្ញុំសុំចំពោះទ្រង់តាមរយៈអំណាចណាពីរបស់ទ្រង់។ ឬអំណាចរបស់ ហូសេន ជាដើម។ ពិតណាស់ថាអំណាចរបស់ណាពី វាធំធេងចំពោះ អល់ឡោះ ហើយដូចគ្នាដែរអំណាចរបស់អ្នកដែល សលីហ៊ីន ។ ប៉ុន្តែបណ្ដា សហាហ្ពាត់ ជាអ្នកចង់បានប្រការល្អជាងគេ។ ចាប់តាំងពី ណាពី ទទួលមរណភាពទៅ ពួកគេមិនដែលសុំតាមរយៈអំណាចរបស់លោកនោះទេ ខណៈដែលផ្នូររបស់លោកក៏នៅទីនោះជាមួយពួកគេដែរ។ ពួកគេបែរជាសុំតាមរយៈឪពុកមារបស់លោកគឺ អាប់ហ្គើស ទៅវិញ។

២- ទូអាសុំពី អល់ឡោះ ដើម្បីបំពេញតម្រូវការរបស់គេដោយស្បថចំពោះណាពីឬវ៉ាលីរបស់ អល់ឡោះ ដូចជាគេថាបពិត្រព្រះជាម្ចាស់! ខ្ញុំបួងសួងចំពោះទ្រង់ដោយវ៉ាលីរបស់ទ្រង់ឈ្មោះ ឬដោយសិទ្ធិណាពីទ្រង់ឈ្មោះ។ ពីព្រោះការស្បថនឹងសត្វលោកជាមួយនឹងសត្វលោកដូចគ្នាគឺច្បាប់ហាមឃាត់។ យ៉ាងណាមិញចំពោះ អល់ឡោះ គឺច្បាប់កាន់តែហាមឃាត់ខ្លាំងជាងនោះទៅទៀត។ ខ្ញុំបម្រើរបស់ អល់ឡោះ គ្មានសិទ្ធិអ្វីទៅលើ អល់ឡោះ ក្រៅពីការប្រតិបត្តិចំពោះទ្រង់នោះទេ។





## ២១- តើជំនឿលើថ្ងៃបរលោកមានអត្ថន័យដូចម្តេច?

វាគឺការជឿជាក់ថាថ្ងៃបរលោកនឹងកើតឡើងប្រាកដមែន ហើយក៏ស្ថិតក្នុងជំនឿនេះផងដែរនោះគឺការជំនឿចំពោះសេចក្តីស្លាប់និងអ្វីដែលកើតមានបន្ទាប់ពីការស្លាប់នេះនូវការសាកល្បងនៅក្នុងផ្នូរ ហើយទារុណកម្មនិងភាពសុខសាន្តនៅក្នុងផ្នូរ។ ក្នុងនោះផងដែរ គឺការជំនឿចំពោះការផ្លុំវិញ្ញាណចូលក្នុងរាងកាយ ការក្រោកឈរនៃមនុស្សលោកចំពោះមុខម្ចាស់របស់ពួកគេ ការចែកបញ្ជីនៃទង្វើរបស់ពួកគេ ការថ្លឹងអំពើល្អនិងអំពើអាក្រក់ ការឆ្លងស្ពាន(ស៊ីរ៉ត) អាងទឹក និងការអន្តរាគម ក្រោយមកការឆ្ពោះទៅរកឋានសួគ៌និងឋាននរក។

## ២២- តើសញ្ញាធំៗនៃថ្ងៃបរលោកមានអ្វីខ្លះ?

ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ពិតប្រាកដណាស់ ថ្ងៃបរលោកនឹងមិនទាន់កើតឡើងទេ លុះត្រាតែពួកអ្នកបានឃើញមុនវាកើតឡើងនូវ ១០សញ្ញាដែលមានដូចជាផ្សែង ឌាច់ហ្ជាល ហ្វាបពះ ថ្ងៃរះពីទិសខាងលិច ណាពីអ៊ីសាចុះមកផែនដី យ៉ាក់ជូជ និង ម៉ាក់ជូជ ឬដីស្រុតបីកន្លែងគឺទិសខាងកើត ទិសខាងលិច និងជ្រោយអារ៉ាប់ ហើយចុងក្រោយភ្លើងឆេះចេញពីប្រទេសយ៉ាម៉ាន់ដេញមនុស្សលោកទៅរកកន្លែងប្រមូលផ្តុំរបស់ពួកគេ។** (មូស្លីម)

## ២៣- តើការសាកល្បងឬហ្វីតណះអ្វីដែលធំបំផុតចំពោះមនុស្សលោក?

ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **តាំងពីការបង្កើតណាពីអាហ្ទាំ រហូតដល់ថ្ងៃបរលោក គ្មាន ហ្វីតណះ ណាធំជាង តាច់ជើល ទេ។** (មូស្លីម)

វានោះគឺជាបុរសម្នាក់ក្នុងចំណោមកូនចៅ អាហ្ទាំ ដែលនឹងមកដល់នាជំនាន់ចុងក្រោយ (អាឃៀត ហ្សាម៉ាន់) ហើយត្រូវគេសរសេរនៅចន្លោះភ្នែកទាំងពីររបស់វាថា (ك ف ر) ដែលត្រូវបានអ្នកមានជំនឿគ្រប់រូបអានវា។ វាគឺជាមនុស្សខ្វាក់ភ្នែកខាងស្តាំ ភ្នែករបស់វាហាក់ដូចជាផ្លែទំពាំងបាយជូរ ដែលលានចេញមកក្រៅ។ វាចេញមកដំបូងបានអះអាងថាខ្លួនវាជាអ្នកផ្សះផ្សា បន្ទាប់មកអះអាងថាខ្លួនវាជាណាពី ហើយក្រោយមកទៀតអះអាងថាវាគឺជាម្ចាស់។ វាបានទៅជួបមនុស្សមួយក្រុម ហើយក៏បានអំពាវនាវពួកគេ តែពួកគេមិនជឿនិងបដិសេធចំពោះពាក្យសម្តីរបស់វា។ ខណៈនោះវាក៏បានចាកចេញពីក្រុមនោះ ហើយអ្វីដែលទៅតាមវានោះនូវទ្រព្យសម្បត្តិរបស់ពួកគេដោយគ្មានសេសសល់អ្វីនៅនឹងដៃពួកគេបន្តិចសោះឡើយ។ បន្ទាប់មកវាក៏មកជួបនឹងមនុស្សមួយក្រុមទៀតដើម្បីអំពាវនាវពួកគេ ហើយពួកគេក៏ឆ្លើយតបចំពោះការអំពាវនាវនោះដោយបានជឿលើវា។ វាបញ្ជាមេឃឱ្យភ្លៀងពេលនោះមេឃក៏បានភ្លៀង។ វាបញ្ជាដីឱ្យដុះពេលនោះដីក៏ដុះនូវអ្វីដែលត្រូវដុះពីក្នុងដី។ វាបានទៅជួបមនុស្សលោកដោយមានទឹក(ឋានសួគ៌)និងភ្លើង(នរក)ដោយភ្លើងរបស់វាគឺជាទឹកដ៏ត្រជាក់ ហើយទឹករបស់វា




គឺជាភ្លើងដ៏ក្តៅ។ អ្នកមានជំនឿគ្រប់រូបចាំបាច់ត្រូវសុំពី អល់ឡោះ ដើម្បីបញ្ចៀសខ្លួនឱ្យឆ្ងាយពីការសាកល្បងនេះនៅរាល់ពេលចុងក្រោយនៃការ សឡាត។ ប្រសិនបើបានជួបនឹងវា គេត្រូវសូត្រផ្តើមដំបូងនៃ ស៊ូរ៉ោះ កះហ្វ៊ី។ យើងត្រូវរត់គេចចេញឱ្យឆ្ងាយពីការជួបនឹងវាដោយខ្លាចចំពោះការសាកល្បងនេះ។ ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ជនណាបានឮដំណឹងរបស់ ឌាច់ហ្ជាល ចូរគេរត់គេចចេញទៅឱ្យឆ្ងាយ។ ខ្ញុំសុំស្បថនឹង អល់ឡោះ ថា : ពិតណាស់ បុរសម្នាក់ទៅជួបនឹងវាដោយនឹកស្មានថាខ្លួនជាអ្នកមានជំនឿ តែក៏ត្រូវជឿលើវាតាមរយៈអ្វីដែលវាបានបង្កើតអំពីប្រការមន្ទិលមិនច្បាស់លាស់ទាំងនោះ។**(អាពូទើវ៉ូទ)

វារស់នៅលើផែនដីរយៈពេល៤០ថ្ងៃ។ មួយថ្ងៃដំបូងប្រៀបដូចជាមួយឆ្នាំ។ ថ្ងៃបន្ទាប់ប្រៀបដូចជាមួយខែ ហើយថ្ងៃបន្ទាប់មកទៀតប្រៀបដូចជាមួយសប្តាហ៍។ ចំណែកថ្ងៃដែលនៅសេសសល់ទៀតគឺដូចនឹងថ្ងៃធម្មតារបស់យើងបច្ចុប្បន្ន។ វាបានដើរសព្វគ្រប់កន្លែងនៅលើផែនដីដោយគ្មានសល់កន្លែងណាឡើយ ក្រៅពី មឹក្កះ និង ម៉ាឌីណា។ បន្ទាប់មកណាពី អ៊ីសា បានចុះពីលើមេឃហើយក៏បានសម្លាប់វា។

**២៤- តើឋានសួគ៌និងឋាននរកមានហើយឬនៅ?** បាទ! ចា៎! អល់ឡោះ បានបង្កើតកន្លែងទាំងពីរនេះមុននឹងទ្រង់បង្កើតមនុស្សលោក។ កន្លែងទាំងពីរនេះមិនវិនាស ហើយក៏មិនមានការរំលោភបំពានដែរ។ អល់ឡោះ បង្កើតឋានសួគ៌សម្រាប់ទទួលមនុស្សដោយការអនុគ្រោះអំពីទ្រង់ ហើយដាក់ពួកគេទៅក្នុងឋាននរកដោយភាពយុត្តិធម៌របស់ទ្រង់។ ពិតណាស់ គេ(អល់ឡោះ)នឹងសម្រួលដល់មនុស្សគ្រប់ៗគ្នា។

**២៥- តើជំនឿលើការកំណត់របស់ អល់ឡោះ មានអត្ថន័យដូចម្តេច?** ជំនឿនេះគឺការជឿជាក់យ៉ាងពិតប្រាកដថា រាល់ប្រការល្អនិងប្រការអាក្រក់គឺជាការវិនិច្ឆ័យនិងកំណត់មកពី អល់ឡោះ ហើយទ្រង់ធ្វើអ្វីមួយទៅតាមការចង់ឬការប៉ងប្រាថ្នារបស់ទ្រង់។ ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ប្រសិនបើ អល់ឡោះ ដាក់ទណ្ឌកម្មចំពោះអ្នកដែលនៅលើមេឃនិងអ្នកដែលនៅលើផែនដី គឺការដាក់ទណ្ឌកម្មទៅលើពួកគេដោយទ្រង់មិនបានធ្វើអយុត្តិធម៌ចំពោះពួកគេឡើយ។ ប្រសិនបើទ្រង់អាណិតស្រឡាញ់ពួកគេវិញនោះ ការស្រឡាញ់របស់ទ្រង់ទៅលើពួកគេល្អប្រសើរជាង អាម៉ាល់ ដែលពួកគេបានធ្វើ។ ប្រសិនបើអ្នកបរិច្ចាគមាសប៉ុនភ្នំ អ៊ូហុត ក្នុងផ្លូវ អល់ឡោះ ក៏ទ្រង់មិនទទួលយកពីអ្នកដែរ លុះត្រាតែអ្នកមានជំនឿនឹងការកំណត់វាសនាមកពី អល់ឡោះ ហើយអ្នកត្រូវដឹងថាអ្វីដែល អល់ឡោះ មិនឱ្យកើតមានចំពោះអ្នកទេនោះ វានឹងមិនអាចកើតលើអ្នកជាដាច់ខាត។ ចំណែកអ្វីដែលទ្រង់បានកំណត់ឱ្យកើត**





មានលើអ្នកវិញនោះ អ្នកនឹងមិនអាចគេចផុតបានឡើយ។ ប្រសិនបើអ្នកបានស្លាប់ដោយគ្មានជំនឿបែបនេះទេនោះ អ្នកនឹងចូលឋាននរក។ (អះម៉ាត់ និងអាពូទើវូទ)

**ជំនឿលើការកំណត់របស់ អល់ឡោះ រួមផ្សំនូវ ៤ប្រការគឺ៖**

១-ជឿជាក់ថា អល់ឡោះ ដឹងទាំងអស់ទោះបីជារឿងកំប៉ិកកំប៉ុកក្តីឬពិស្តារក្តី។

២-ជឿជាក់ថា អល់ឡោះ បានកត់ត្រារឿងទាំងអស់នោះទុកក្នុងបញ្ជីដែលត្រូវបានគេថែរក្សា (ឡៅហ៊ិល ម៉ះហ្វូស)។ ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **អល់ឡោះ បានកត់ត្រាកំណត់ហេតុលើអ្វីដែលទ្រង់បង្កើត (ម៉ាឃ្លូក) មុនពេលទ្រង់បង្កើតមេឃជាច្រើនជាន់និងផែនដីចំនួន៥០ពាន់ឆ្នាំរួចហើយ។** (មូស្លីម)

៣- ជឿចំពោះចេតនារបស់ អល់ឡោះ ដែលគ្មានអ្វីអាចបញ្ឈប់បាន ហើយលទ្ធភាពរបស់ទ្រង់ ដែលគ្មានអ្វីអាចមានសមត្ថភាពដូចទ្រង់។ អ្វីដែលទ្រង់មានចេតនា វានឹងកើតមាន ហើយអ្វីដែលទ្រង់មិនមានចេតនាទេនោះ វានឹងមិនអាចកើតមានបានជាដាច់ខាត។

៤- ជឿជាក់ថា អល់ឡោះ គឺជាអ្នកដែលបង្កើត ហើយធ្វើឱ្យមានអ្វីៗទាំងអស់ ហើយរាល់អ្វីៗដែលផ្សេងពីទ្រង់គឺជា ម៉ាឃ្លូក របស់ទ្រង់។

## ២៦- តើម៉ាឃ្លូកមានលទ្ធភាពក្នុងការចង់ឬចំណង់ពិតប្រាកដដែរទេ?

សម្រាប់មនុស្សលោកគឺមានចំណង់និងជម្រើស។ ប៉ុន្តែ មិនអាចចេញផុតពីចំណង់របស់ អល់ឡោះ ទេ។ អល់ឡោះ បានមានបន្ទូលថា៖ ﴿وَمَا تَشَآءُونَ إِلَّآ أَن يَشَآءَ ٱللَّهُ﴾ មានន័យថា៖ **ពួកអ្នកមិនអាចមានបំណងធ្វើអ្វីមួយបានឡើយ លើកលែងតែ អល់ឡោះ មានចេតនាប៉ុណ្ណោះ។** (អាល់អ៊ីនសាន : ៣០)

ហើយណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ចូរពួកអ្នកខិតខំបំពេញនូវការងាររបស់ខ្លួន។ ពិតណាស់ គេ(អល់ឡោះ) នឹងសម្រួលដល់មនុស្សគ្រប់ៗគ្នាតាមសម្រាប់អ្វីដែលគេបង្កើតមក)។** (អាល់ពូខរី និងមូស្លីម)

អល់ឡោះ បានផ្តល់ដល់យើងនូវខួរក្បាល ត្រចៀក ភ្នែក ដើម្បីឱ្យយើងបែងចែករវាងប្រការល្អនិងប្រការអាក្រក់។ តើខួរក្បាលអាចក្បត់នឹងការពិតបានដែរទេ? ដោយគេពោលថាពិតណាស់ អល់ឡោះ បានកំណត់ឱ្យខ្ញុំធ្វើប្រការអាក្រក់។ ទោះបីជាគេពោលយ៉ាងនេះក្តី ក៏មនុស្សមិនអាចអភ័យទោសឱ្យបានដែរ។ គេត្រូវទទួលទណ្ឌកម្មហើយត្រូវបានគេនិយាយទៅកាន់វិញថាពិតណាស់ អល់ឡោះ ក៏បានកំណត់ទណ្ឌកម្មនេះលើអ្នកដូចគ្នា។ ការយកលេសនិងការដោះសារចំពោះការកំណត់របស់ អល់ឡោះ គឺត្រូវបានគេហាមឃាត់ហើយតាមពិតវាជាការភូតកុហក។ អល់ឡោះ បានមានបន្ទូលថា៖

﴿سَيَقُولُ ٱلَّذِينَ أَشْرَكُوا۟ لَوْ شَآءَ ٱللَّهُ مَآ أَشْرَكْنَا وَلَآ ءَابَآؤُنَا وَلَا حَرَّمْنَا مِن شَىْءٍ ۚ كَذَٰلِكَ كَذَّبَ ٱلَّذِينَ مِن قَبْلِهِم﴾




មានន័យថា៖ ពួកដែលបានធ្វើ ស្ហ៊ីរិគ នឹងនិយាយថាប្រសិនបើ អល់ឡោះ មានចេតនា ពួកយើងនិងជីដូនជីតារបស់ពួកយើងមិនបានធ្វើ ស្ហ៊ីរិគ ឡើយ ហើយពួកយើងក៏មិនបម្រាមនូវប្រការណាមួយដែរ។ ដូច្នោះដែរ ពួកដែលពីមុនពួកគេក៏បានបដិសេធអ៊ីចឹងដែរ។ (អាល់អាន់អាម : ១៤៨)

២៧- តើអៀហសានគឺជាអ្វី? ណាពី មូ៉ហាំម៉ាត់ ត្រូវបានគេសួរអំពី អៀហសាន ហើយលោកក៏បានឆ្លើយថា៖ មានន័យថា៖ អៀហសាន នោះគឺអ្នកត្រូវគោរពសក្ការៈចំពោះ អល់ឡោះ ហាក់ដូចជាអ្នកមើលឃើញទ្រង់អ៊ីចឹង។ បើទោះបីជាជាក់ស្តែង អ្នកមិនបានមើលឃើញទ្រង់ទេនោះ តែអ្នកត្រូវជឿជាក់ថាទ្រង់កំពុងតែមើលឃើញអ្នក។(មូស្លីម)

ហើយវាមានកម្រឹតខ្ពង់ខ្ពស់ជាងគេនៅក្នុងសាសនា។

២៨- តើតាវហេទមានប៉ុន្មានប្រភេទ? តាវហេទ មានបីប្រភេទគឺ ១- តាវហេទ រ៉ូពូ ពីយ៉ះ វាគឺការប្រគល់រាល់ទង្វើទាំងឡាយរបស់ អល់ឡោះ ចំពោះទ្រង់ ដូចជាការបង្កើត ការផ្តល់ រីសគី ការពង្រោះ និងផ្សេងៗទៀត។ ពួក កាហ្វៀរ បានទទួលស្គាល់ចំពោះផ្នែកនេះនៃ តាវហេទ មុនពេលគេតែងតាំងណាពី។

២- តាវហេទ អ៊ូលូ ហ៊ីយ៉ះ វាគឺជាការប្រគល់ចំពោះ អល់ឡោះ រាល់ទង្វើទាំងឡាយរបស់យើង ដូចជាការ សឡាត ការប៉ង ការបរិច្ចាគ ហើយផ្សេងៗទៀត។ ដោយសារតែត្រូវប្រគល់រាល់ទង្វើទាំងឡាយចំពោះ អល់ឡោះ ទើបបានជាទ្រង់តែងតាំងបណ្តា រ៉ស៊ូល ហើយបញ្ចុះ គីតាបៗ។

៣- តៅហេទ អាសម៉ាក វ៉ាស៊ីហ្វាត គឺការទទួលស្គាល់ចំពោះអ្វីដែល អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់បានទទួលស្គាល់អំពីបណ្តាឈ្មោះដ៏ប្រពៃនិងលក្ខណៈដ៏ខ្ពង់ខ្ពស់សម្រាប់ អល់ឡោះ ដោយគ្មានកែប្រែ ហើយបដិសេធនឹងអ្វីដែលបានថែងឬការគិតស្រមៃនិងប្រៀបប្រដូចនឹងលក្ខណៈណាមួយនៃ ម៉ាឃ្លូក។

២៩-តើនរណាជា(វ៉ាលី)? វ៉ាលី គឺជាអ្នកមានជំនឿ ដែលស្មោះត្រង់និងកោតខ្លាច។ អល់ឡោះ បានមានបន្ទូលថា៖

﴿أَلَآ إِنَّ أَوْلِيَآءَ ٱللَّهِ لَا خَوْفٌ عَلَيْهِمْ وَلَا هُمْ يَحْزَنُونَ ۝٦٢ ٱلَّذِينَ ءَامَنُوا۟ وَكَانُوا۟ يَتَّقُونَ﴾ មានន័យថា៖ តើមិនមែនទេឬបណ្តាវ៉ាលីៗរបស់ អល់ឡោះ ពិតជាគ្មានការភ័យខ្លាចទេ ហើយពួកគេក៏មិនព្រួយបារម្ភអ្វីដែរ។ ពួកគេគឺជាបណ្តាអ្នកដែលមានជំនឿ ហើយពួកគេបានកោតខ្លាច អល់ឡោះ។ (យ៉ូសុះ : ៦២-៦៣)

ណាពី មូ៉ហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ ការពិត វ៉ាលី របស់ខ្ញុំគឺ អល់ឡោះ និងបណ្តាអ្នកស្មោះសដែលមានជំនឿ។(អាល់ពូខរី នងមូស្លីម)

៣០- តើអ្វីជាកាតព្វកិច្ចរបស់យើងចំពោះបណ្តាមិត្តភក្តិរបស់ណាពីមូ៉ហាំម៉ាត់?





យើងចាំបាច់ត្រូវស្រឡាញ់ពួកគេនិងអនុគ្រោះដល់ពួកគេ ហើយមិនបំពានលើពួកគេមិនថាក្នុងចិត្តឬពាក្យសម្ដី។ យើងត្រូវផ្សព្វផ្សាយពីភាពវិសេសវិសាលរបស់ពួកគេ និងត្រូវបញ្ឈប់នូវការឈ្លោះទាស់ទែងជាមួយពួកគេ។ ពួកគេមិនមែនជាមនុស្សដែលត្រូវបានគេថៃរក្សាឬបញ្ចៀសពីប្រការអាក្រក់នោះទេ ក៏ប៉ុន្តែពួកគេជាអ្នកឧស្សាហ៍ព្យាយាម។ សម្រាប់អ្នកដែលព្យាយាមស្វែងយល់ ហើយអនុវត្តបានត្រឹមត្រូវ នោះគេនឹងទទួលបានផលបុណ្យទ្វេដង ហើយអ្នកដែលព្យាយាមស្វែងយល់ហើយអនុវត្តមិនបានត្រឹមត្រូវវិញ គេនឹងទទួលបានផលបុណ្យមួយ ហើយកំហុសរបស់គេត្រូវបានអធ្យាស្រ័យ។ ពួកគេមានភាពប្រពៃក្នុងការលុបបំបាត់អំពើអាក្រក់ដែលបានកើតមានក្នុងចំណោមពួកគេ ហើយពួកគេក៏មានភាពវិសេសវិសាលផ្សេងៗគ្នាផងដែរ។ មនុស្សដប់នាក់ដែលប្រពៃក្នុងចំណោមពួកគេមានដូចជា អាហ្ពូ ប៉ាកើរ (أبو بكر), បន្ទាប់មក អ៊ូម៉ើរ (عمر), បន្ទាប់មក ឧស្មាន (عثمان), បន្ទាប់មកទៀត អាលី (علي), ហើយបន្ទាប់មកទៀត តល់ហះ (طلحة), និង ហ្ស៊ូពៀរ (الزبير), អាប់ឌុល រ៉ោះម៉ាន ពិន អោហ្វ (عبدالرحمن بن عوف), សាអាដ អ៊ិបនូ អាប៊ី វ៉ាកស (سعد ابن أبي وقاص), សាអ៊ីដ ពិន ហ្សៃដ (سعيد بن زيد), អាហ្ពូ អ៊ូហ្ពៃតះ ពិន អាល់ជើររ៉ោះ (أبو عبيدة ابن الجراح)។ បន្ទាប់មកទៀតគឺអ្នក ម៉ូហ៊ើជីរីន (ដែលបានភៀសខ្លួនពី ម៉ឹក្កះ ទៅ ម៉ាឌីណះ) ទូទៅនិងអ្នកដែលបានពលីជីវិតក្នុងសង្គ្រាម ហ្ពើទើរ អំពីអ្នក ម៉ូហ៊ើជីរីន និងអ្នក អាន់សត ហើយបន្ទាប់មកទៀតអ្នកដែលនៅសល់នៃអ្នក អាន់សត និងបណ្ដាសហាហ្ពាត់ ទាំងអស់។ ណាពីបានមានប្រសាសន៍ថា៖ មានន័យថា៖ **ចូរពួកអ្នកកុំជេរប្រមាថបណ្ដា សហាហ្ពាត់ របស់ខ្ញុំ។ ខ្ញុំសូមស្បថចំពោះម្ចាស់ ដែលជីវិតរបស់ខ្ញុំនៅក្នុងកណ្ដាប់ដៃរបស់ទ្រង់ថា ពិតណាស់ប្រសិនបើនរណាម្នាក់នៃពួកអ្នកបានបរិច្ចាគមាសប៉ុនភ្នំ អ៊ូហុត ក៏មិនស្មើនឹងមួយកម្បង់ដៃរបស់ពួកគេឬពាក់កណ្ដាលវាឡើយ។** (អាល់ពូខរី និងមូស្លីម)

លោកក៏បានថ្លែងនៅក្នុងប្រសាសន៍ផ្សេងទៀតថា៖ មានន័យថា៖ **ជនណាបានជេរប្រមាថចំពោះបណ្ដា សហាហ្ពាត់ របស់ខ្ញុំនោះ គេនឹងទទួលបានការដាក់បណ្ដាសារពី អល់ឡោះ និង ម៉ាឡាអ៊ីកាត់ (ទេវតា) និងមនុស្សលោកទាំងអស់។**

(អាត់តប់រ៉នី)

**៣១- តើយើងអាចលើកតម្កើងរ៉សូលឬឱ្យលើសពីកម្រិតដែល អល់ឡោះ ផ្ដល់ឱ្យគាត់បានដែរឬទេ?** ពិតណាស់ ចៅហ្វាយរបស់យើង ម៉ូហាំម៉ាត់ គឺជាមនុស្សដ៏មហាប្រពៃនិងខ្ពង់ខ្ពស់ក្នុងចំណោមអ្វីៗដែល អល់ឡោះ បានបង្កើតដោយគ្មានសង្ស័យអ្វីឡើយ។ ប៉ុន្តែ យើងមិនអាចបន្ថែមក្នុងការសរសើរឬលើកតម្កើងលោកឱ្យហួសហេតុដូចដែលពួក ណាសរ៉នី (គ្រឹស្ទាន) ធ្លាប់បន្ថែមក្នុងការលើកតម្កើង

ចំពោះ អ៊ីសា កូន ម៉ារីយ៉ំ បានឡើយ។ ពីព្រោះលោកបានហាមឃាត់យើងទាំងអស់គ្នាពីការធ្វើដូច្នោះ តាមរយៈប្រសាសន៍មួយរបស់លោកថា៖ មានន័យថា៖ **ចូរពួកអ្នកកុំលើកតម្កើងខ្ញុំដូចដែលពួក ណាសរ៉នី បានលើកតម្កើងកូនប្រុសរបស់ ម៉ារីយ៉ំ ឱ្យសោះ។ ពិតណាស់ ខ្ញុំគឺជាបម្រើម្នាក់។ ដូច្នេះចូរពួកអ្នកហៅខ្ញុំថា បម្រើរបស់ អល់ឡោះ និងរ៉ស៊ូលរបស់ទ្រង់។** (អាល់ពូខរី)

ការកោតសរសើរនេះគឺសំដៅលើការបន្ថែមឱ្យហួសហេតុក្នុងការសរសើរឬលើកតម្កើងដោយជ្រុលនិយម។

**៣២- តើពួកអះលី គីតាប(យ៉ាហ៊ូទីនិងណាសរ៉នី)ជាអ្នកមានជំនឿមែនទេ?**

ពួក យ៉ាហ៊ូទី និង ណាសរ៉នី និងបណ្ដាសាសនាផ្សេងៗដែលគេកាន់តាម គឺជាពួក កាហ្វៀរ (ប្រឆាំង) ទោះបីជាពួកគេកាន់តាមសាសនាមួយដែលប្រភពដើមរបស់វាត្រឹមត្រូវក៏ដោយ។ ជនណាដែលមិនព្រមបោះបង់ចោលសាសនារបស់ខ្លួន ក្រោយពេលគេបានតែងតាំងណាពី មូ៉ហាំម៉ាត់ ជារ៉ស៊ូល ហើយមិនចូលឥស្លាមទេនោះគឺ៖ ﴿فَلَن يُقْبَلَ مِنْهُ وَهُوَ فِي الْآخِرَةِ مِنَ الْخَاسِرِينَ﴾

មានន័យថា៖ **អល់ឡោះ មិនទទួលយក(ទង្វើល្អ)ពីគេឡើយ។ នាថ្ងៃបរលោកវិញ គេនឹងស្ថិតនៅក្នុងចំណោមពួកដែលខាតបង់។**(អាលីអ៊ីមរ៉ន ៨៥)

ប្រសិនបើអ្នកឥស្លាមមិនជឿជាក់ចំពោះភាព កាហ្វៀរ (ប្រឆាំង) របស់ពួក អះលី គីតាប ឬក៏នៅសង្ស័យចំពោះភាពមិនពិតនៃសាសនារបស់ពួកគេទេនោះ គេនឹងក្លាយជាអ្នក កាហ្វៀរ(ប្រឆាំង)។ ពីព្រោះវាផ្ទុយនឹងច្បាប់របស់ អល់ឡោះ និងណាពីរបស់ទ្រង់ចំពោះការប្រឆាំងរបស់ពួកគេ។ អល់ឡោះ បានមានបន្ទូលថា៖ ﴿وَمَن يَكْفُرْ بِهِ مِنَ الْأَحْزَابِ فَالنَّارُ مَوْعِدُهُ﴾ មានន័យថា៖ **អ្នកដែលបដិសេធនឹងវាក្នុងចំណោមក្រុមទាំងនោះ (យ៉ាហ៊ូទី ណាសរ៉នី និងពួកគ្មានជំនឿ) គឺភ្លើងនរកជាកន្លែងសន្យារបស់គេ។** (ហ៊ូទ : ១៧)

បានន័យថាអ្នកដែលយកសាសនាផ្សេងៗមកកាន់តាមក្រៅពីឥស្លាម គេនឹងចូលឋាននរក។ ណាពី មូ៉ហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ខ្ញុំសូមស្បថចំពោះម្ចាស់ដែលជីវិតរបស់ មូ៉ហាំម៉ាត់ នៅក្នុងកណ្ដាប់ដៃរបស់ទ្រង់ថា មិនមាននរណាម្នាក់ដែលបានស្ដាប់ឮពីខ្ញុំក្នុងប្រជាជាតិនេះ ទោះបីជាគេនោះជា យ៉ាហ៊ូទី ក្ដីឬ ណាសរ៉នី ក្ដី ហើយបានស្លាប់ទៅដោយមិនមានជំនឿលើខ្ញុំទេនោះ គឺគេនឹងស្ថិតក្នុងចំណោមអ្នកដែលចូលឋាននរក។** (មូស្លីម)

**៣៣- តើយើងអាចធ្វើអយុត្តិធម៌ឬបំពានលើអ្នកកាហ្វៀរបានដែរទេ?**

យុត្តិធម៌គឺជាកត្តាចាំបាច់ដែលត្រូវប្រកាន់ខ្ជាប់។ អល់ឡោះ បានមានបន្ទូលថា៖ ﴿إِنَّ اللَّهَ يَأْمُرُ بِالْعَدْلِ وَالْإِحْسَانِ﴾ មានន័យថា៖



ពិតណាស់ អល់ឡោះ បញ្ជាឱ្យប្រកាន់នូវភាពយុត្តិធម៌និងគុណធម៌។ (អាន់ណះល៍)
ចំណែកឯការអយុត្តិធម៌គឺត្រូវបានច្បាប់ហាមឃាត់ដោយយោងទៅតាមបន្ទូលរបស់ អល់ឡោះ ថា៖ មានន័យថា៖ ពិតណាស់ យើងបានហាមឃាត់លើខ្លួនឯងពីភាព អយុត្តិធម៌ ហើយយើងក៏បានហាមឃាត់វាចំពោះពួកអ្នកដែរ។ ហេតុដូច្នេះ ចូរពួក អ្នកកុំប្រព្រឹត្តនូវអំពើអយុត្តិធម៌ណាមួយឱ្យសោះ។ (មូស្លីម) អ្នកដែលត្រូវបានគេ បំពានលើ គឺនឹងធ្វើឱ្យអ្នកដែលបានបំពានលើគេនោះមានការខ្វះខាតចំពោះអ្វី ដែលគេបានធ្វើនាថ្ងៃបរលោក។ ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មាន ន័យថា៖ តើពួកអ្នកដឹងទេថានរណាទៅជាជនក្ស័យធន? ពួកគេឆ្លើយថា៖ ជន ដែលក្ស័យធនក្នុងចំណោមយើងទាំងអស់គ្នា គឺជាជនដែលមិនមានទ្រព្យសម្បត្តិ ហើយគ្មានអ្វីទាល់តែសោះ។ ណាពីបានពោលថា ជនដែលក្ស័យធនចំពោះ អ៊ុម៉ាត់ (ពលរដ្ឋ) របស់ខ្ញុំគឺជាជនដែលនៅថ្ងៃបរលោក គេបាននាំទៅជាមួយនូវការ សឡាត ការបួស និង ហ្សាកាត់ ហើយក៏បាននាំយកទៅជាមួយផងដែរនូវការជេរ ប្រមាថអ្នកនេះ ចោទប្រកាន់អ្នកនោះ។ រំលោភយកទ្រព្យសម្បត្តិអ្នកនេះ បង្ហូរ ឈាមអ្នកនោះ និងវាយតប់គេឯង។ ពេលនោះគេនឹងយករាល់ទង្វើល្អរបស់ជន នោះទៅឱ្យបណ្ដាអ្នកទាំងអស់នោះ។ ប្រសិនបើទង្វើល្អរបស់គេខ្ទេចខ្ទីអស់គ្មាន សល់ មុនពេលគេកាត់ក្ដីចំពោះអ្វីដែលគេនៅជាប់ពាក់ព័ន្ធនោះ គេនឹងយកទង្វើ អាក្រក់របស់ពួកគេទាំងនោះទៅទម្លាក់ឱ្យជននោះ បន្ទាប់មកគេក៏ទម្លាក់ជននោះ ទៅក្នុងភ្លើងនរក។(មូស្លីម)

**៣៤- តើហ្ពិតអះជាអ្វី?** អ៊ិបនូ រ៉ជិព ~ បានពោលថា៖ អត្ថន័យនៃពាក្យ ហ្ពិត អះ គឺសំដៅលើប្រការអ្វីដែលបានបង្កើតថ្មី ដែលមិនមានប្រភពដើមនៅក្នុងច្បាប់ នៃសាសនាអំពីប្រការនោះ។ ចំណែកអ្វីដែលធ្លាប់មានគំរូឬមានប្រភពនៅក្នុង ច្បាប់អំពីប្រការនោះ គឺមិនមែនជា ហ្ពិតអះ ក្នុងន័យនៃច្បាប់សាសនានោះទេ តែ ជួនកាលវាជា ហ្ពិតអះ ក្នុងន័យភាសាប៉ុណ្ណោះ។

**៣៥- តើនៅក្នុងសាសនាឥស្លាមមានហ្ពិតអះល្អនិងហ្ពិតអះអាក្រក់ដែរទេ?**
មាន អាយិត និង ហាទីស ជាច្រើនដែលបានស្ដីបន្ទោសរាល់ប្រការ ហ្ពិតអះ តាម ខ្លឹមសារច្បាប់សាសនា។ ដូចជាអ្វីដែលគេបានបង្កើតថ្មី ហើយមិនមានប្រភពនៅ ក្នុងច្បាប់សាសនា។ ដោយណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖
មានន័យថា៖ ជនណាធ្វើទង្វើ(អាម៉ាល់) អ្វីមួយដែលមិនមែនជាកិច្ចការ សាសនារបស់យើងទេនោះ វានឹងត្រូវគេបដិសេធចោល។(អាល់ពូខរី និងមូស្លីម)
លោកបានថ្លែងនៅក្នុងប្រសាសន៍ផ្សេងទៀតថា មានន័យថា៖ ពិតណាស់ រាល់ ប្រការដែលគេបង្កើតថ្មីនៅក្នុងសាសនាគឺជាប្រការ ហ្ពិតអះ ហើយរាល់ប្រការ

**ហ្លិតអះ គឺវង្វេង**។(អាពូទើវ៉ូទ)
ចំណែក អ៊ីម៉ាំ ម៉ាលិក ~ វិញ បានលើកឡើងក្នុងករណី ហ្លិតអះ ក្នុងន័យនៃច្បាប់សាសនាថា៖ មានន័យថា៖ **ជនណាបានបង្កើតកិច្ចការថ្មីណាមួយនៅក្នុងសាសនាឥស្លាមដោយយល់ឃើញថាប្រការនោះល្អ គឺគេជាអ្នកដែលចាត់ទុកថា ណាពី ម៉ូហាំម៉ាត់ បោកប្រាស់សាររបស់លោក**។ ដោយសារ អល់ឡោះ បានមានបន្ទូលថា៖ ﴿ٱلۡيَوۡمَ أَكۡمَلۡتُ لَكُمۡ دِينَكُمۡ وَأَتۡمَمۡتُ عَلَيۡكُمۡ نِعۡمَتِي﴾ មានន័យថា៖ **ថ្ងៃនេះយើងបានបំពេញសាសនារបស់ពួកអ្នកឱ្យពួកអ្នក និងបានបង្គ្រប់ នៀកម៉ាត់របស់យើងឱ្យពួកអ្នក**។ (អាល់ម៉ាអ៊ីដះ ៣)

ក្នុងនោះផងដែរក៏មាន ហាទីស មួយចំនួនបានលើកសរសើរដល់ ហ្លិតអះ ដែលមានអត្ថន័យក្នុងលក្ខណៈភាសា។ វាគឺជាប្រការដែលច្បាប់ធ្លាប់បាននាំមក ក៏ប៉ុន្តែវាត្រូវបានគេភ្លេច ហើយណាពីក៏ជំរុញទៅលើប្រការនោះដោយការរំឭកដល់មនុស្សដូចដែលលោកបានមានប្រសាសន៍ថា៖ មានន័យថា៖ **ជនណាបានធ្វើទង្វើល្អណាមួយនៅក្នុងសាសនាឥស្លាមមុនគេ គាត់នឹងទទួលបានផលបុណ្យនោះនិងផលបុណ្យរបស់អ្នក ដែលធ្វើទង្វើនោះតាមគាត់ដោយមិនបានកាត់បន្ថយផលបុណ្យរបស់អ្នកដែលធ្វើទង្វើល្អនោះតាមគាត់បន្តិចណាឡើយ**។(មូស្លីម)
ក្នុងន័យតាមភាសានេះដែរគឺសម្ដីរបស់ អ៊ូម៉ើរ មានន័យថា៖ **នេះគឺជាទង្វើដ៏ល្អឬក៏នេះគឺជាប្រការ ហ្លិតអះ** ដែលល្អ។ គាត់ចង់សំដៅទៅលើ សឡាត តារ៉ាវេស។ ការពិតវាធ្លាប់មាននៅក្នុងច្បាប់ឥស្លាម ហើយរ៉ស៊ូលុលឡោះ បានជំរុញលើការប្រតិបត្តិវាផងដែរដោយលោកបាន សឡាត តារ៉ាវេស ចំនួនបីយប់។ បន្ទាប់មកលោកក៏បានបោះបង់វាដោយសារខ្លាច អល់ឡោះ ដាក់វាជា ហ្វើរទូ (កាតព្វកិច្ច) លើអ្នកឥស្លាម។ អ៊ូម៉ើរ បានអនុវត្តវា ហើយក៏បានប្រមូលផ្ដុំមនុស្សដើម្បី សឡាត តារ៉ាវេស នេះឡើងវិញ។

**៣៦-តើម៉ូណាហ្វិក(មនុស្សពុតត្បុត)មានប៉ុន្មានប្រភេទ?** មនុស្សពុតត្បុតឬគេឱ្យឈ្មោះថា ម៉ូណាហ្វិក មានពីរប្រភេទគឺ
**១-** ម៉ូណាហ្វិក ផ្នែកគោលជំនឿ (ម៉ូណាហ្វិក ធំ) វាគឺជាការសម្ដែងឱ្យឃើញខាងក្រៅថាជាអ្នកមានជំនឿ ចំណែកខាងក្នុងវិញគឺប្រឆាំង ហើយវាធ្វើឱ្យបុគ្គលនោះចេញពីសាសនា។ ប្រសិនបើគេនៅតែរឹងរូស ហើយស្លាប់នៅក្នុងសភាពបែបនេះគឺគេស្លាប់ក្នុងនាមជាអ្នក កាហ្វៀរ (ប្រឆាំង)។ អល់ឡោះ បានមានបន្ទូលថា៖ ﴿إِنَّ ٱلۡمُنَٰفِقِينَ فِي ٱلدَّرۡكِ ٱلۡأَسۡفَلِ مِنَ ٱلنَّارِ﴾ មានន័យថា៖ **ពិតណាស់បណ្ដាពួកពុតត្បុត (ម៉ូណាហ្វីគីន) នឹងស្ថិតនៅក្នុងបាតក្រោមបង្អស់នៃឋាននរក**។ (អាន់នីសាក : ១៤៥)
ខ្លះៗអំពីលក្ខណៈរបស់ពួកវាគឺពួកវាបោកប្រាស់ អល់ឡោះ និងបណ្ដាអ្នកមាន



ជំនឿ ហើយពួកវាចំអកដល់បណ្ដាអ្នកមានជំនឿ ថែមទាំងសហការជាមួយពួក កាហ្វៀរ(ប្រឆាំង) ដើម្បីធ្វើបាបបណ្ដាអ្នកឥស្លាម។ ចំណែករាល់ទង្វើល្អរបស់ពួកវាវិញគឺធ្វើដើម្បីចង់បាននូវផលប្រយោជន៍លោកិយ ឬគ្រាន់តែដើម្បីលោកិយប៉ុណ្ណោះ។ ២- ម៉ូណាហ្វិក ផ្នែកទង្វើ (ម៉ូណាហ្វីក តូច) វាមិនធ្វើឱ្យគេចេញពីឥស្លាមទេ។ ប៉ុន្តែ វាស្ថិតក្នុងសភាពគ្រោះថ្នាក់ដែលអាចនឹងឈានទៅដល់ ម៉ូណាហ្វិក ធំ ប្រសិនបើគេមិនព្រម តៅហ្ពាត់ (សារភាពទោសកំហុស)។ សញ្ញារបស់វាមានដូចជាកាលណាគេនិយាយ គេកុហក ហើយប្រសិនបើគេសន្យា គេក្បត់សន្យា។ បើកាលណាមានការឈ្លោះទាស់ទែងគ្នាវិញ គេក្រអឺតក្រទមមិនព្រមដោះស្រាយដោយសន្តិវិធីឡើយ ហើយប្រសិនបើត្រូវបានគេទុកចិត្ត គេបោកប្រាស់។ ហេតុដូច្នេះហើយ បានជាបណ្ដា សហាហ្ពាត់ { ទាំងអស់មានការខ្លាចចំពោះ ម៉ូណាហ្វិក ផ្នែកទង្វើ នេះយ៉ាងខ្លាំង។ កូនប្រុសរបស់ អាហ្ពី ម៉ូឡៃកះ ~ បានពោលថា៖ ខ្ញុំបានរស់ទាន់ សហាហ្ពាត់ របស់ណាពី ម៉ូហាំម៉ាត់ ជាង៣០នាក់។ ពួកគេទាំងនោះខ្លាចភាព ម៉ូណាហ្វិក កើតមានលើខ្លួនពួកគេ។ អ៊ីព្រហ៊ីម អាត់ តៃមី ~ បានពោលថា៖ ខ្ញុំមិនដែលបង្ហាញពាក្យសម្ដីរបស់ខ្ញុំទៅលើទង្វើរបស់ខ្ញុំឡើយ។ ដោយសារតែខ្ញុំខ្លាចធ្វើឱ្យខ្លួនឯងក្លាយជាមនុស្សកុហក។ ហាសាន់ អាល់ ហ្ពិសរី ~ បានពោលថា៖ មិនមាននរណាម្នាក់ខ្លាចចំពោះប្រការនោះទេ ក្រៅពីអ្នកដែលមានជំនឿ ហើយក៏មិនមាននរណាម្នាក់ជឿលើវាដែរ ក្រៅពីអ្នក ម៉ូណាហ្វិក ប៉ុណ្ណោះ។ អ៊ូម៉ើរ បានពោលទៅកាន់ ហ៊ូហៃហ្វះ } ថា៖ ខ្ញុំសួរអ្នកដោយស្បថនឹង អល់ឡោះ! តើរ៉សូលុលឡោះ ធ្លាប់បានរាប់ឈ្មោះរបស់ខ្ញុំបញ្ចូលក្នុងចំណោមពួកគេ (ម៉ូណាហ្វីគីន) ប្រាប់អ្នកដែរទេ? គាត់ឆ្លើយថា៖ ទេ! ហើយខ្ញុំនឹងមិនប្រាប់រឿងនេះទៅឱ្យនរណាម្នាក់បានដឹងបន្ទាប់ពីអ្នកទៀតទេ។

**៣៧- តើបាបកម្ម(ទូសា)អ្វីដែលធំបំផុតចំពោះ អល់ឡោះ ?** គឺធ្វើ ស្ហ៊ីរិគ ជាមួយ អល់ឡោះ។ ដោយទ្រង់បានមានបន្ទូលថា៖ ﴿إِنَّ ٱلشِّرۡكَ لَظُلۡمٌ عَظِيمٞ﴾ មានន័យថា៖ **ពិតណាស់ អំពើ ស្ហ៊ីរិគ គឺជាបាបកម្មមួយដ៏ធំ**។(លុកម៉ាន : ១៣) ហើយខណៈពេលដែលគេបានសួរ រ៉សូលុលឡោះ ថា៖ តើបាបកម្មអ្វីដែលធំជាងគេ? លោកបានឆ្លើយថា៖ មានន័យថា៖ **គឺអ្នកធ្វើឱ្យមានដៃគូជាមួយនឹង អល់ឡោះ ខណៈទ្រង់តែម្នាក់គត់ ដែលបានបង្កើតរូបអ្នក**។ (អាល់ពូខរី និងមូស្លីម)

**៣៨- តើអំពើស្ហ៊ីរិគមានប៉ុន្មានប្រភេទ?** អំពើ ស្ហ៊ីរិគ មានពីរប្រភេទគឺ

១- ស្ហ៊ីរិគ ធំ វាធ្វើឱ្យចេញពីឥស្លាម ហើយ អល់ឡោះ មិនអភ័យទោសឱ្យចំពោះអ្នកដែលបានធ្វើវាឡើយ។ ដោយ អល់ឡោះ បានមានបន្ទូលថា៖ ﴿إِنَّ ٱللَّهَ لَا يَغۡفِرُ أَن يُشۡرَكَ بِهِۦ وَيَغۡفِرُ مَا دُونَ ذَٰلِكَ لِمَن يَشَآءُ﴾ មានន័យថា៖

ពិតណាស់ អល់ឡោះ មិនអភ័យទោសឱ្យអ្នកដែលធ្វើ ស្ហ៊ីរិគ ចំពោះទ្រង់ឡើយ។ តែទ្រង់នឹងអភ័យទោសឱ្យចំពោះបាបកម្មផ្សេងពីនោះចំពោះអ្នកណាដែលទ្រង់មានចេតនា។(អាន់នីសាក : ៤៨)

**ស្ហ៊ីរិគ ធំ ចែកចេញទៅជាបួនផ្នែកគឺ**

១.១- ស្ហ៊ីរិគ ក្នុងការទូអា និងការសុំអ្វីមួយ។ ១.២- ស្ហ៊ីរិគ ក្នុងការនៀត និងគោលបំណងឬចេតនាដោយធ្វើអំពើល្អណាមួយដើម្បីអ្នកផ្សេងពី អល់ឡោះ។ ១.៣- ស្ហ៊ីរិគ ក្នុងការគោរព ដូចជាធ្វើតាមមេដឹកនាំឬអ្នកប្រាជ្ញណាម្នាក់ក្នុងការហាមឃាត់នូវប្រការដែល អល់ឡោះ បានអនុញ្ញាតឬអនុញ្ញាតនូវប្រការដែលទ្រង់បានហាមឃាត់។ ១.៤- ស្ហ៊ីរិគ ក្នុងការស្រឡាញ់ ដូចជាយើងស្រឡាញ់នរណាម្នាក់ដូចនឹងការស្រឡាញ់ចំពោះ អល់ឡោះ ដែរ។

២- ស្ហ៊ីរិគ តូច តែវាមិនធ្វើឱ្យចេញពីឥស្លាមទេ ហើយវាក៏ចែកចេញជាពីរផ្នែកដែរគឺ
២.១- ផ្នែកខាងក្រៅ ទោះបីតាមរយៈពាក្យសម្ដីដូចជាការស្បថជាមួយអ្វីផ្សេងពី អល់ឡោះ ឬក៏ពោលថា៖ អ្វីដែល អល់ឡោះ មានចេតនានិងចេតនារបស់អ្នក ឬក៏ពោលថា៖ ប្រសិនបើគ្មាន អល់ឡោះ និងនរណាម្នាក់ទេនោះ...) ឬតាមរយៈទង្វើដូចជាការពាក់កងដៃ ឬខ្សែអំបោះដើម្បីបញ្ចៀសពីគ្រោះថ្នាក់។ ជាមួយគ្នានេះដែរ គឺការពាក់ខ្សែគាថាដោយខ្លាចអំពីជំងឺ អ៊ីន(ភ្នែក) ឬខ្លាចពីប្រផ្នូលអាក្រក់ដូចជាជំនឿចំពោះសត្វស្លាប ឬឈ្មោះណាមួយ ឬពាក្យសម្ដី ឬកន្លែងណាមួយ និងផ្សេងៗទៀត ។
២.២- ផ្នែកខាងក្នុង វាគឺជា ស្ហ៊ីរិគ នៅក្នុងការ នៀត តាំងចិត្តឬគោលបំនង ដូចជាធ្វើអ្វីមួយចង់ឱ្យគេឃើញឬឱ្យគេឮជាដើម។

**៣៩- តើស្ហ៊ីរិគធំនិងស្ហ៊ីរិគតូចខុសគ្នាដូចម្ដេច?** ភាពខុសគ្នាខ្លះនៃ ស្ហ៊ីរិគ ទាំងពីរនេះគឺ ស្ហ៊ីរិគ ធំ ត្រូវបានគេកាត់ក្ដីចំពោះអ្នកដែលបានធ្វើវាដោយចេញពីឥស្លាមនៅក្នុងលោកិយ ហើយអមតៈនៅក្នុងឋាននរកនាថ្ងៃបរលោក។ រីឯ ស្ហ៊ីរិគ តូច វិញគឺមិនត្រូវបានគេកាត់ក្ដីថាជាអ្នក កាហ្វៀត ទេ នៅក្នុងលោកិយ ហើយក៏មិនអមតៈក្នុងឋាននរកដែរ។ ដូចដែល ស្ហ៊ីរិគ ធំ ធ្វើឱ្យ អល់ឡោះ លុបបំបាត់នូវបណ្ដា អាម៉ាល់ (ទង្វើ) របស់គេទាំងអស់ដែល ស្ហ៊ីរិគ តូច វិញធ្វើឱ្យ អល់ឡោះ លុបបំបាត់ត្រឹមតែ អាម៉ាល់ (ទង្វើ) ដែលគេធ្វើវាតែប៉ុណ្ណោះ។ ដូច្នេះដែរ វានៅមានចម្ងល់នៃភាពខុសគ្នានេះថា៖ តើ ស្ហ៊ីរិគ តូច មិនត្រូវបានគេអភ័យទោសឱ្យ លើកលែងតែគេ តៅហ្ពាត់ (សារភាពកំហុស) ដូច ស្ហ៊ីរិគ ធំ ដែរឬក៏វាដូចនឹង ស្ហ៊ីរិគ ធំ ដែលនៅក្រោមការចេតនារបស់ អល់ឡោះ ឬយ៉ាងណា? ចំពោះប្រការទាំងពីរនេះ គឺវាគ្រោះថ្នាក់បំផុតដែលយើងទាំងអស់គ្នាត្រូវព្យាយាមចៀសវាងឱ្យឆ្ងាយពីវា។

**៤០-ចំពោះស្ហ៊ីរិគតូច តើគេត្រូវការពារមុនពេលធ្លាក់ចូលក្នុងវា ឬត្រូវពិន័យ**



ប្រសិនបើធ្លាក់ចូលហើយនោះ? យើងត្រូវការពារឬប្រុងប្រយ័ត្នពីភាព រីយ៉ាក ដោយត្រូវធ្វើនូវទង្វើអ្វីមួយដើម្បី អល់ឡោះ តែមួយគត់។ ចំណែកអ្វីដែលអាចជួយសម្រួលបាននោះ គឺតាមរយៈនៃការ ទូអា ដែលណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ឱបណ្តាមនុស្សលោក! ចូរពួកអ្នកខ្លាចពីប្រការ ស្ទីរិគ នេះ។ ពិតណាស់ វាតូចជាងជានជើងស្រមោចដែលដើរពេលយប់ទៅទៀត។ មានគេសួរទៅកាន់លោកថា៖ ឱរ៉ស៊ូលុលឡោះ! តើយើងត្រូវធ្វើដូចម្តេចទៅ បើវាតូចដូច្នេះ? លោកឆ្លើយថា៖ ចូរពួកអ្នក ទូអា ថា៖** (اللَّهُمَّ إِنَّا نَعُوْذُ بِكَ مِنْ أَنْ نُشْرِكَ بِكَ شَيْئًا نَعْلَمُهُ وَنَسْتَغْفِرُكَ لِمَا لاَ نَعْلَمُ) **( ឱ អល់ឡោះ ជាម្ចាស់! ពិតណាស់យើងសុំពីទ្រង់ឱ្យបញ្ចៀសយើងអំពីប្រការ ស្ទីរិគ ចំពោះទ្រង់នូវប្រការណាមួយដែលយើងបានដឹង ហើយយើងសុំការអភ័យទោសពីទ្រង់រាល់ប្រការណាដែលយើងមិនបានដឹង។**(អះម៉ាត់)

ចំណែកឯការពិន័យចំពោះអ្នកដែលបានស្បថជាមួយនឹងអ្វីផ្សេងពី អល់ឡោះ វិញគឺណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ជនណាបានស្បថជាមួយនឹង ឡាត ហើយនិង អ៊ុសហ្សា (ឈ្មោះរូបសំណាកដែលពួក ម៉ូសរីគីន មីក្កះ គោរពសក្ការៈនាសម័យនោះ។ ចូរឱ្យគេពោលឡើងវិញថា៖** لاَ إِلَهَ إِلاَّ اللهُ **។** (អាល់ពូខរី និងមូស្លីម)

ឯការពិន័យចំពោះអ្នកដែលមានប្រផ្នូលអាក្រក់ដោយជំនឿទៅលើសត្វស្លាបឬសត្វផ្សេងៗវិញនោះគឺណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ជនណាដែលមានជំនឿលើប្រផ្នូលអាក្រក់តាមរយៈសត្វ ហើយធ្វើឱ្យប្រផ្នូលនោះហាមឃាត់រូបគេអំពីកិច្ចការអ្វីមួយ គឺគេប្រាកដជា ស្ទីរិគ នឹង អល់ឡោះ។ ពេលនោះ សហាហ្បាត់ បានសួរថា៖ តើយើងត្រូវដូចម្តេចទៅដើម្បីការពារពីប្រការនោះ? លោកមានប្រសាសន៍ថា៖ អ្នកត្រូវសូត្រថា៖** (اللَّهُمَّ لاَ خَيْرَ إِلاَّ خَيْرُكَ وَلاَ طَيْرَ إِلاَّ طَيْرُكَ وَلاَ إِلَهَ غَيْرُكَ) **( ឱ អល់ឡោះ ជាម្ចាស់! គ្មានប្រការល្អណាមួយទេ ក្រៅពីប្រការល្អរបស់ទ្រង់។ គ្មានប្រផ្នូលអាក្រក់ណាទេក្រៅពីប្រផ្នូលអាក្រក់របស់ទ្រង់ ហើយក៏គ្មានម្ចាស់ណាក្រៅពីទ្រង់ឡើយ។** (អះម៉ាត់)

៤១- តើការហៀរ(ប្រឆាំង)មានប៉ុន្មានប្រភេទ? ការហៀរ (ប្រឆាំង) មានពីរប្រភេទគឺ
១- ការហៀរ ធំ ដែលធ្វើឱ្យចេញពីឥស្លាម ហើយវាចែកចេញជាប្រាំផ្នែកគឺ
១-១- ប្រឆាំង ដោយការកុហក ១-២- ប្រឆាំង ដោយការអំណួតលាយឡំជាមួយនឹងការជឿ ១-៣- ប្រឆាំង ដោយការមន្ទិលសង្ស័យ ១-៤- ប្រឆាំង ដោយការបដិសេធ ១-៥- ប្រឆាំង ដោយពុតត្បុត (ម៉ូណាហ្វិក)។ ២- ការហៀរ តូច វាគឺជាការប្រឆាំងដោយប្រព្រឹត្តនូវអំពើបាប(ម៉ាក់សៀត)ដែលច្បាប់បានហាមឃាត់




ហើយវាមិនធ្វើឱ្យចេញពីឥស្លាមនោះទេដូចជាការសម្លាប់អ្នកឥស្លាម..។

**៤២-តើច្បាប់នៃការសច្ចាដូចម្តេចដែរ?** ណាពី ម៉ូហាំម៉ាត់ មិនពេញចិត្តចំពោះការសច្ចាទេ។ លោកបានមានប្រសាសន៍ថា៖ មានន័យថា៖ **ពិតណាស់ វាមិនបាននាំមកនូវរឿងល្អនោះទេ។** (អាល់ពូខរី)
នេះប្រសិនបើការសច្ចានោះស្មោះសចំពោះ អល់ឡោះ។ តែប្រសិនបើការសច្ចានោះជាមួយអ្នកផ្សេងពី អល់ឡោះ ដូចជាការសច្ចាចំពោះផ្នូរឬចំពោះ វ៉ាលី ណាមួយវិញនោះគឺ ហារ៉ាម ដែលមិនត្រូវបានច្បាប់អនុញ្ញាតជាដាច់ខាត ហើយក៏មិនត្រូវធ្វើតាមការសច្ចានោះដែរ។

**៤៣- តើច្បាប់នៃការទៅជួបគ្រូទាយឬគ្រូធ្មប់ដូចម្តេចដែរ?**
វាមិនត្រូវបានច្បាប់អនុញ្ញាតិឡើយពោលគឺ ហារ៉ាម។ ប្រសិនបើយើងទៅជួបពួកគេដើម្បីចង់បានផលប្រយោជន៍ពីពួកគេដោយយើងមិនបានជឿថាពួកគេដឹងពីរឿងអាថ៌កំបាំងនោះទេគឺ អល់ឡោះ មិនទទួលយកការ សឡាត របស់យើងចំនួន៤០ថ្ងៃដោយយោងទៅតាមប្រសាសន៍របស់រ៉ស៊ូលុលឡោះថា៖ មានន័យថា៖ **ជនណាបានទៅជួបគ្រូទាយ ហើយបានសួរគេនូវរឿងអ្វីមួយនោះ អល់ឡោះ មិនទទួល សឡាត របស់គេចំនួន៤០យប់។**(មូស្លីម)
ប្រសិនបើយើងទៅជួបពួកគេ ហើយបានជឿលើពួកគេដោយអះអាងថាពួកគេអាចដឹងនូវប្រការអាថ៌កំបាំងវិញនោះ គឺប្រាកដជាក្លាយជា កាហ្វៀត ដោយរ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា៖ មានន័យថា៖ **ជនណាបានទៅជួបគ្រូទាយឬគ្រូធ្មប់ ហើយបានជឿនូវអ្វីដែលគេបាននិយាយប្រាកដជា កាហ្វៀរ នឹងអ្វីដែលគេបានបញ្ចុះលើ ម៉ូហាំម៉ាត់ (ឥស្លាម)។**(អាពូទើវ៉ូទ)

**៤៤-តើពេលណាការជឿថាភ្លៀងធ្លាក់ដោយសារផ្កាយក្លាយជាស្ទីរិគធំ ហើយពេលណាជាស្ទីរិគតូច?**
ជនណាជឿជាក់ថាផ្កាយមានឥទ្ធិពលបង្កើតឱ្យមានជាភ្លៀងដោយគ្មានចេតនាពី អល់ឡោះ ទេនោះ គឺជា ស្ទីរិគ ធំ។ ប្រសិនបើគេជឿជាក់ថាផ្កាយអាចមានឥទ្ធិពលបង្កើតឱ្យមានភ្លៀងតាមរយៈចេតនារបស់ អល់ឡោះ ហើយវាគឺជាហេតុដែលបណ្តាលឱ្យភ្លៀង ហើយ អល់ឡោះ ធ្វើឱ្យផ្កាយដើរតាមគន្លងធម្មតា កាលណាស្តែងចេញនូវផ្កាយណាមួយនោះ វានឹងបង្កឱ្យមានភ្លៀងគឺជា ស្ទីរិគ តូច។ ពីព្រោះការចាត់ទុកផ្កាយជាមូលហេតុនៃការធ្លាក់ភ្លៀងនេះ មិនមានភស្តុតាងក្នុងច្បាប់ឥស្លាម ឬវិញ្ញាណ ឬខួរក្បាលឡើយ។ តែបើយកវាជាភស្តុតាងក្នុងការបែងចែករវាងឆ្នាំនិងរដូវវេលា គឺគ្មានបញ្ហាអ្វីនោះទេ។

**៤៥- តើកាតព្វកិច្ចត្រូវធ្វើដូចម្តេចចំពោះថ្នាក់ដឹកនាំឥស្លាម?**



យើងចាំបាច់ត្រូវស្តាប់និងគោរពតាមពួកគេចំពោះចំណុចសកម្មឬចំណុចខ្វះខាតរបស់ពួកគេ។ យើងមិនត្រូវចាកចេញពីពួកគេទេ ទោះបីមិនអាចរស់នៅក្បែរគ្នាបានក៏ដោយ។ យើងមិនត្រូវបួងសួងសុំឱ្យពួកគេនូវប្រការអាក្រក់ ហើយក៏មិនត្រូវប្រើប្រាស់អាវុធដើម្បីគេចចេញពីការគោរពពួកគេដែរ។ ប៉ុន្តែ យើងត្រូវបួងសួងសុំឱ្យពួកគេមានការផ្សះផ្សាគ្នា ចេះអធ្យាស្រ័យគ្នា ទទួលបានការចង្អុលបង្ហាញ និងយល់ពីកំហុស ហើយដកខ្លួនចេញពីវា។ ការគោរពចំពោះពួកគេគឺជាការគោរពមួយក្នុងចំណោមការគោរពចំពោះ អល់ឡោះ ដរាបណាពួកគេមិនប្រើយើងនូវប្រការ ម៉ាក់សៀត ដែលច្បាប់បានហាមឃាត់។ ប្រសិនបើពួកគេប្រើឱ្យធ្វើនូវទង្វើ ម៉ាក់សៀត នេះ គឺមិនត្រូវគោរពតាមជាដាច់ខាត តែត្រូវធ្វើតាមនូវទង្វើណាល្អ។ ណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **អ្នកត្រូវស្តាប់និងគោរពតាមថ្នាក់ដឹកនាំ ទោះបីជាពួកគេវាយខ្នងរបស់អ្នក ហើយរឹបអូសយកទ្រព្យសម្បត្តិរបស់អ្នកក៏ដោយ។**(មូស្លឹម)

**៤៦- តើយើងអាចសួរចង់ដឹងអំពីបុព្វហេតុនៃបទបញ្ញារបស់ អល់ឡោះ និងអ្វីដែលទ្រង់ហាមឃាត់បានដែរទេ?** ពិតជាបាន ប៉ុន្តែពុំត្រូវដាក់លក្ខខណ្ឌនៃជំនឿ (អ៊ីម៉ាន) និងការអាម៉ាល់របស់គេ ទាល់តែដឹងពីគតិបណ្ឌិត និងយល់ដោយសមហេតុផល។ វាគ្រាន់តែជួយពង្រឹងជំនឿរបស់អ្នកមានជំនឿដើម្បីឋិតនៅលើផ្លូវសច្ចៈត្រឹមត្រូវ។ ក៏ប៉ុន្តែត្រូវប្រគល់ខ្លួនទាំងស្រុង មិនសួររកភស្តុតាងដើម្បីបំពេញភាពជាខ្ញុំបម្រើនិងការមានជំនឿចំពោះ អល់ឡោះ ដោយសារគតិបណ្ឌិតរបស់ទ្រង់ដ៏ពេញលេញដូចជាពួកសហាហ្ពាត់។

**៤៧- តើបន្ទូលរបស់ អល់ឡោះ ﴿مَّآ أَصَابَكَ مِنۡ حَسَنَةٖ فَمِنَ ٱللَّهِۖ وَمَآ أَصَابَكَ مِن سَيِّئَةٖ فَمِن نَّفۡسِكَ﴾ សំដៅលើអ្វី?** បន្ទូលរបស់ អល់ឡោះ ﴿مَّآ أَصَابَكَ مِنۡ حَسَنَةٖ فَمِنَ ٱللَّهِۖ وَمَآ أَصَابَكَ مِن سَيِّئَةٖ فَمِن نَّفۡسِكَ﴾ មានន័យថា៖ **អ្វីដែលពួកអ្នកបានទទួលអំពីប្រការល្អនោះគឺមកពី អល់ឡោះ។ ឯអ្វីដែលពួកអ្នកបានទទួលអំពីប្រការអាក្រក់វិញគឺមកពីខ្លួនឯង។**(អាន់នីសាក : ៧៩) ឃ្លាខាងលើបានន័យថា៖ ប្រការល្អត្រង់ចំណុចនេះគឺសំដៅលើ នៀកម៉ាត់ ហើយប្រការអាក្រក់វិញគឺគ្រោះ។ ទាំងអស់នោះគឺជាការកំណត់ពី អល់ឡោះ។ រាល់ប្រការល្អគឺវាត្រឡប់ទៅរក អល់ឡោះ ពីព្រោះទ្រង់ជាដែលធ្វើឱ្យវាល្អ ហើយប្រការអាក្រក់វិញគឺទ្រង់បង្កើតវាដើម្បីជាបុព្វហេតុដែលតាមរយៈបុព្វហេតុនេះនឹងបង្ហាញឱ្យឃើញពីប្រការល្អនោះ។ រាល់ទង្វើរបស់ អល់ឡោះ ទាំងអស់គឺសុទ្ធតែល្អដោយណាពី ម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា៖ មានន័យថា៖ **រាល់ប្រការល្អទាំងអស់គឺស្ថិតក្នុងកណ្តាប់ដៃទាំងពីររបស់អ្នក (អល់ឡោះ) រីឯប្រការអាក្រក់វិញគឺមិនមែនត្រឡប់ទៅលើអ្នក(អល់ឡោះ) នោះទេ។** (មូស្លឹម)





រាល់ទង្វើរបស់បម្រើទាំងឡាយគឺ អល់ឡោះ ជាអ្នកបង្កើត ហើយវាជាលទ្ធផលរបស់បម្រើទាំងឡាយនៅក្នុងពេលដដែល។ ដូចដែល អល់ឡោះ បានមានបន្ទូលថា៖ ﴿ فَأَمَّا مَنْ أَعْطَىٰ وَاتَّقَىٰ ۝٥ وَصَدَّقَ بِالْحُسْنَىٰ ۝٦ فَسَنُيَسِّرُهُ لِلْيُسْرَىٰ ﴾ មានន័យថា៖ **ចំណែកឯអ្នកណាដែលបានបរិច្ចាគទាននិងកោតខ្លាច អល់ឡោះ។ និងអ្នកដែលមានជំនឿលើអំពើល្អនោះ។ យើងនឹងរៀបចំឱ្យគេនូវមាគ៌ាដែលងាយស្រួល។**(អាល់ឡៃល៍ :៥-៦-៧)

## ៤៨- តើយើងអាចនិយាយថាគាត់ជាអ្នកពលី(ស្ហាហ៊ីដ)បានដែរទេ?

ការអះអាងចំពោះនរណាម្នាក់ថាជាអ្នកពលី(ស្ហាហ៊ីដ) មានន័យថាគេគឺជាអ្នកដែលត្រូវចូលឋានសួគ៌។ នីកាយរបស់អ្នកដើរតាម ស៊ុណ្ណះ គឺមិនអនុញ្ញាតឱ្យនិយាយទៅលើបុគ្គលណាម្នាក់នៃអ្នកឥស្លាមថា គេជាអ្នកដែលស្ថិតក្នុងចំណោមអ្នកដែលចូលឋានសួគ៌ឬឋាននរកនោះទេ លើកលែងនរណាដែលណាពី ម៉ូហាំម៉ាត់ បានប្រាប់ប៉ុណ្ណោះ។ ពីព្រោះការជាក់ស្តែង វាជារឿងអាថ៌កំបាំង ហើយយើងក៏មិនអាចដឹងបានដែរថា តើមនុស្សស្លាប់ទៅស្ថិតនៅលើសភាពបែបណានោះទេ។ រាល់អាម៉ាល់ អាស្រ័យទៅលើដំណាក់កាលចុងក្រោយ ចំណែកឯការ នៀត វិញគឺមានតែ អល់ឡោះ ទេជាអ្នកដឹង។ ប៉ុន្តែ យើងសង្ឃឹមចំពោះអ្នកដែលល្អថានឹងទទួលផលបុណ្យ ហើយភ័យខ្លាចចំពោះអ្នកដែលអាក្រក់ថានឹងទទួលទណ្ឌកម្ម។

## ៤៩.តើយើងអាចកាត់សេចក្តីទៅលើអ្នកឥស្លាមណាម្នាក់ច្បាស់ថាជាអ្នក(កាហ្វៀរ)បានដែរឬទេ?

យើងមិនអាចអះអាងទៅលើបុគ្គលឥស្លាមណាម្នាក់ថាជាអ្នក កាហ្វៀរ ឬជាអ្នក ស្ទីរិគ ឬក៏ជាអ្នក ម៉ូណាហ្វិក បានទេ ប្រសិនបើគ្មានប្រការណាមួយបង្ហាញពីការពិតរបស់ពួកគេទេនោះ។ យើត្រូវបណ្តោយគេជាបណ្តោះអាសន្នទុករឿងរបស់គេនោះឱ្យ អល់ឡោះ ជាអ្នកកាត់សេចក្តី។

## ៥០- តើយើងអាច(តវ៉ាហ្វ)ជុំវិញអ្វីផ្សេងក្រៅពី(កាក់ហ្ពះ)បានដែរទេ?

មិនមានកន្លែងណាមួយនៅលើផែនដីនេះ ដែលយើងអាច តវ៉ាហ្វ ជុំវិញវាបានក្រៅពី កាក់ហ្ពះ ដែលត្រូវបានគេលើកតម្កើងនោះឡើយ។ យើងក៏មិនអាចប្រៀបធៀបវាទៅនឹងកន្លែងណាមួយ ទោះបីជាកន្លែងនោះធ្លាប់ជាកន្លែងថ្កុំថ្កើងក៏ដោយ។ ជនណា តវ៉ាហ្វ ជុំវិញកន្លែងផ្សេងក្រៅពី កាក់ហ្ពះ ក្នុងការលើកតម្កើងនោះ ប្រាកដជាអ្នកប្រឆាំងនឹង អល់ឡោះ។





# ការប្រតិបត្តិផ្លូវចិត្ត

**អល់ឡោះ បានបង្កើតចិត្ត ហើយធ្វើឱ្យវាក្លាយជាស្តេច ហើយអវយវៈទាំងឡាយជាកូនទាហានរបស់វា។ បើសិនជាស្តេចនោះល្អគឺកូនទាហានទាំងអស់ល្អ។**

រ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា៖ មានន័យថា៖ **ពិតណាស់ នៅក្នុងខ្លួនមានសាច់មួយដុំ បើសិនជាសាច់មួយដុំនោះល្អ ខ្លួនប្រាណទាំងមូលល្អ។ តែបើសិនជាសាច់មួយដុំនោះខូច ខ្លួនប្រាណទាំងមូលត្រូវខូច។ ពិតណាស់ វាគឺបេះដូង។**(អាល់ពូខរី និងមូស្លីម)

ចិត្តគឺជាកន្លែងនៃជំនឿ និងការកោតខ្លាច ឬជាកន្លែងគូហ្វរ ក្បត់ និងស្ហ៊ីរិក។ ណាពីគាត់បានមានប្រសាសន៍ថា៖ មានន័យថា៖ **ការកោតខ្លាចគឺនៅទីនេះ គាត់បានចង្អុលទៅកាន់ដើមទ្រូងរបស់គាត់ចំនួនបីដង។** (មូស្លីម)

- អ៊ីម៉ានគឺ ជំនឿ វាចា និងការអនុវត្ត។ ជឿក្នុងចិត្ត ពោលនឹងអណ្តាត អនុវត្តដោយចិត្តនិងកាយវិការ។ ចិត្តមានអ៊ីម៉ាន់និងជឿជាក់។ បន្ទាប់មកបង្កើតបានជាសាក្សីនៅលើអណ្តាត។ បន្ទាប់មក ចិត្តបានអនុវត្តតាមមុខងាររបស់វាដូចជាការស្រឡាញ់ ការកោតខ្លាច ការសង្ឃឹម ហើយអណ្តាតបានកម្រើកដោយការហ្ស៊ីកៀរ និងសូត្រអាល់គួរអាន ហើយកាយវិការកម្រើកដោយការស៊ូជោតនិងរូកុ។ ជាក់ស្តែង ចិត្តមានអំពើល្អដែលត្រូវឧទ្ទិសចំពោះ អល់ឡោះ។ ខ្លួនប្រាណដើរតាមចិត្ត។ គ្មានអ្វីមួយដក់ជាប់ក្នុងចិត្តលើកលែងតែត្រដាងឡើងលើខ្លួនប្រាណតាមការចាំបាច់ដោយរូបភាពណាមួយ។
- ការអនុវត្តផ្លូវចិត្តមានន័យថា ការអនុវត្តទាំងឡាយដែលកន្លែងរបស់វាឋិតនៅក្នុងចិត្ត ហើយជាប់ពាក់ព័ន្ធនឹងចិត្ត។ ការអនុវត្តដ៏សំខាន់និងធំធេងបំផុតគឺអ៊ីម៉ាន់ជឿចំពោះ អល់ឡោះ។ ដែលជំនឿនេះមាននៅក្នុងចិត្ត ហើយការជឿជាក់ និងការស្តាប់បង្គាប់ក៏ចេញពីចិត្តផងដែរ។ លើសពីនេះ សេចក្តីស្រឡាញ់ដែលកើតមាននៅក្នុងចិត្តរបស់ខ្ញុំបម្រើម្នាក់ចំពោះម្ចាស់របស់គេ ការកោតខ្លាច និងសេចក្តីសង្ឃឹម កាតោវហ្គាត់សារភាពកំហុស និងតាវ៉ក្កាល់ ការអត់ធ្មត់ ការជឿជាក់ ការយូស្ហក។ល។
- រាល់ការអនុវត្តផ្លូវចិត្តនីមួយៗមានភាពផ្ទុយរបស់វាគឺជំនឿផ្លូវចិត្តដូចជាចិត្តជ្រះថ្លាផ្ទុយនឹងការចង់បានមុខមាត់។ ការជឿជាក់ផ្ទុយនឹងការសង្ស័យ។ សេចក្តីស្រឡាញ់ផ្ទុយនឹងការស្អប់ខ្ពើម។ល។ បើសិនជាយើងភ្លេចពុំបានកែលម្អចិត្តរបស់យើងទេ អំពើបាបរបស់យើងនឹងដុះស្នឹម ហើយអំពើបាបនេះនឹងបំផ្លាញចិត្តរបស់យើង។ ណាពីបានមានប្រសាសន៍ថា៖ មានន័យថា៖ (**ខ្ញុំបម្រើម្នាក់នៅពេលគេធ្វើខុស គឺកំហុសរបស់គេជាចំណុចពណ៌ខ្មៅ បើសិនជាគេលុបចេញ សុំអភ័យទោសពី អល់ឡោះ ហើយតាវហ្គាត់គឺចំណុចពណ៌ខ្មៅត្រូវលុបបាត់។ បើសិនជាប្រព្រឹត្តម្តង**





ទៀតគឺចំណុចពណ៌ខ្មៅនោះនឹងកើនឡើង កាន់តែប្រព្រឹត្តកាន់តែកើនឡើងរហូតដល់វាគ្របដណ្តប់លើវា ហើយនោះគឺជាបាបកម្មដែល អល់ឡោះ បានមានបន្ទូលថា មានន័យថា : ទេ! ផ្ទុយទៅវិញ អ្វី(បាបកម្ម)ដែលពួកគេប្រព្រឹត្តនោះ បានគ្របដណ្តប់លើចិត្តរបស់ពួកគេ។ (អាតទៀរមីហ្ស៊ី)

**ហើយរ៉សូលុលឡោះបានមានបន្ទូលទៀតថា**

**មានន័យថា៖** គេបង្ហាញហ្វិតណះដល់ចិត្តមនុស្សដូចជាគេត្បាញកន្ទេលម្តងមួយសរសៃៗ។ ចិត្តណាមួយដែលជ្រាស នឹងវាគឺចិត្តនោះមានស្នាមចំណុចពណ៌ខ្មៅមួយចំណុច។ រាល់ចិត្តណាមួយដែលបដិសេធគឺនឹងមានស្នាមពណ៌សមួយចំណុច។ រហូតដល់ចិត្តទាំងពីរប្រភេទនេះ មួយសដូចភ្នំសហ្វា គ្មានហ្វិតណះណាអាចបង្គ្រោះថ្នាក់ដល់គេនោះទេដរាបណានៅតែមានមេឃ មានដី(ដរាបណាលោកមិនទាន់រលាយ)។ រីឯចិត្តមួយទៀតប្រែជាពណ៌ខ្មៅល្អក់ ចិត្តនោះដូចក្អមផ្កាប់ លែងស្គាល់ខុសត្រូវ ក្រៅពីកំពេលដែលជ្រាបចូលក្នុងវានោះឡើយ។ (មូស្លីម)

- ការយល់ដឹងពីការគោរពសក្ការៈផ្លូវចិត្តចាំបាច់នឹងសំខាន់ជាងការស្គាល់ការប្រតិបត្តិផ្លូវកាយ។ ពីព្រោះវាគឺជាមូលដ្ឋានគ្រឹះ ហើយការប្រតិបត្តិផ្លូវកាយគ្រាន់តែជាមែកធាងប៉ុណ្ណោះ ហើយជាកត្តាបំពេញបន្ថែម ហើយជាផ្លែផ្កានៃការសក្ការៈផ្លូវចិត្ត។ រ៉សូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ អល់ឡោះ ទ្រង់មិនទតមើលរូបភាពរបស់ពួកអ្នកនិងទ្រព្យសម្បត្តិរបស់ពួកអ្នក។ ក៏ប៉ុន្តែ ទ្រង់ទតមើល ចិត្តរបស់ពួកអ្នកនិងអំពើរបស់ពួកអ្នក។ ចិត្តគឺជាកន្លែងចំណេះដឹង ការត្រិះរិះពិចារណានិងការគិត។ (មូស្លីម)

ដូច្នេះ ភាពល្អប្រសើរជាងគ្នារវាងមនុស្សលោកនៅចំពោះ អល់ឡោះ អាស្រ័យលើអ្វីដែលមាននៅក្នុងចិត្តដូចជាអ៊ីម៉ាន់ ភាពជឿជាក់ សេចក្តីជ្រះថ្លា។ល។ អាល់ហាសាន់ ពើសរីយ៍ បាននិយាយថា សូមស្បថចំពោះ អល់ឡោះ អាពូបាកើរ មិនមែនឈ្នះពួកគេដោយសារសឡាត បួសនោះទេ។ គឺឈ្នះពួកគេដោយសារជំនឿដែលមាននៅក្នុងចិត្តរបស់គាត់។

- **ការប្រតិបត្តិផ្លូវចិត្តប្រសើរជាងការប្រតិបត្តិផ្លូវកាយមានច្រើនផ្នែក**

១-ភាពខ្វះចន្លោះនៅក្នុងការប្រតិបត្តិផ្លូវចិត្តអាចបំផ្លាញការប្រតិបត្តិផ្លូវកាយ។ ដូចជាការប្រតិបត្តិចង់ឱ្យគេឃើញ ចង់បានមុខមាត់។

២-ការប្រតិបត្តិផ្លូវចិត្តគឺជាមូលដ្ឋានគ្រឹះ អ្វីដែលខុសឆ្គងដោយពាក្យសម្តីឬកាយវិការដោយគ្មានបំណងគឺគេមិនប្រកាន់ទោសពៃរ៍ទេ។

៣-វាគឺជាមូលហេតុដែលទទួលបាននូវឋានៈដ៏ខ្ពង់ខ្ពស់នៅក្នុងឋានសួគ៌ដូចជាចិត្តលះបង់មិនលោភលន់។ ៤-វាពិបាកជាងការប្រតិបត្តិផ្លូវកាយ។ អិបនូ អាល់មុងកាឌៀរ បាន



និយាយថាខ្ញុំលុតដំចិត្តរបស់ខ្ញុំ៤០ឆ្នាំរហូតដល់ខ្ជាប់ខ្ជួនចំពោះខ្ញុំ។
៥- វាមានឥទ្ធិលល្អប្រសើរដូចជាការស្រឡាញ់ក្នុងនាម អល់ឡោះ។
៦-វាទទួលបានផលបុណ្យធំធេង។ អាពូហ៊ើរ៉ោកបាននិយាយថា គិតមួយម៉ោងប្រសើរជាងងើបថ្វាយបង្គំមួយយប់។
៧- វាគឺជាអ្នកធ្វើឱ្យអវយវៈផ្លូវកាយមានចលនា។
៨- វាអាចជំនួសការប្រតិបត្តិផ្លូវកាយដូចជានៀតធ្វើសហ្ជាកោះដោយគ្មានលុយ។
៩- ផលបុណ្យរបស់វាគ្មានដែនកំណត់នោះទេដូចជាការអត់ធ្មត់។
១០-ផលបុណ្យរបស់វានៅតែបន្ត សូម្បីអវយវៈផ្លូវកាយបានបញ្ឈប់ពីការងារក៏ដោយ។
១១- វាកើតមានមុនការប្រតិបត្តិផ្លូវកាយ ហើយនៅជាមួយវាផងដែរ។

**ចិត្តឆ្លងកាត់ច្រើនសណ្ឋានមុននឹងអនុវត្តតាមអវយវៈគឺ**

១- ប្រផ្នូលគឺជាគំនិតដំបូងដែលផុសឡើងនៅក្នុងចិត្ត។
២- បញ្ញត្តិគឺជាអ្វីដែលដក់ជាប់ក្នុងចិត្ត។ ៣- គិតក្នុងចិត្តគឺការស្ទាក់ស្ទើរ តើគួរធ្វើឬមិនធ្វើ?។ ៤- ចេតនាគឺច្បាស់ក្នុងចិត្តនៅពេលធ្វើអ្វីមួយ។
៥-ការប្ដេជ្ញាចិត្តគឺជាចេតនាដ៏ខ្លង់ខ្លានិងការសម្រេចចិត្តធ្វើអ្វីមួយ។ បីចំណុចដំបូងគ្មានផលបុណ្យសម្រាប់ការគិតពីអំពើល្អ ហើយគ្មានបាបដែរបើគិតពីអំពើអាក្រក់។ រីឯចេតនាឬបំណង បើគិតពីអំពើល្អទទួលបានផលល្អមួយ បើគិតពីអំពើអាក្រក់គឺគ្មានទោសទេ។ បើសិនជាចេតនាក្លាយជាប្ដេជ្ញាវិញគឺបើសិនជាគេប្ដេជ្ញាចិត្តធ្វើអំពើល្អគេនឹងបានផលល្អ ហើយបើសិនជាគេប្ដេជ្ញាចិត្តធ្វើអំពើអាក្រក់គឺនឹងបានផលបាប បើទោះជាគេពុំបានប្រព្រឹត្តក៏ដោយ។ ពីព្រោះចេតនាជាមួយលទ្ធភាពគឺចាំបាច់ត្រូវសម្រេចនូវកម្មឬអំពើនោះ។ អល់ឡោះ ជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖ ﴿ إِنَّ ٱلَّذِينَ يُحِبُّونَ أَن تَشِيعَ ٱلۡفَٰحِشَةُ فِي ٱلَّذِينَ ءَامَنُواْ لَهُمۡ عَذَابٌ أَلِيمٌ ﴾ មានន័យថា៖ **ពិតណាស់ ពួកអ្នកដែលពេញចិត្តចង់ឱ្យរីករាលដាលអំពើអបាយមុខក្នុងចំណោមពួកអ្នកមានជំនឿគឺសម្រាប់ពួកគេទារុណកម្មដ៏ឈឺចាប់បំផុត។**(អាន់នូរ ១៩)
រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **បើសិនជាមូស្លីមពីរនាក់កាន់ដាវសម្លាប់គ្នាគឺអ្នកសម្លាប់គេ និងអ្នកគេសម្លាប់ត្រូវចុះនរកទាំងពីរនាក់។ ខ្ញុំសួរគាត់ថា ម្នាក់នេះសម្លាប់គេ ចុះអ្នកគេសម្លាប់ម៉េចបានត្រូវចុះនរកដែរ? គាត់បានមានប្រសាសន៍ថា ម្នាក់ៗសុទ្ធតែមានបំណងចង់សម្លាប់គ្នាទៅវិញទៅមក។** (អាល់ពូខរី)

**បើសិនជាគេបោះបង់អំពើបទល្មើសបន្ទាប់ពីប្ដេជ្ញាចិត្តធ្វើគឺត្រូវបែងចែកជាបួនប្រភេទ:**

១- បោះបង់វាដោយការកោតខ្លាចចំពោះ អល់ឡោះ គឺគេនឹងផ្ដល់ផលបុណ្យ។
២-បោះបង់ដោយសារខ្លាចមនុស្សគឺនឹងទទួលផលបាប

ពីព្រោះការបោះបង់អំពើបាបជាអ៊ីហ្គ្លាហ្វាត់ ហើយចាំបាច់ត្រូវតែធ្វើដើម្បី អល់ឡោះ តែមួយគត់។ ៣-បោះបង់វាដោយអសមត្ថភាព ហើយក៏មិនបានប្រើមធ្យោបាយដើម្បីសម្រេចអំពើនោះដែរ។ បែបនេះក៏ត្រូវទទួលផលបាបកម្មដែរ ដោយសារការប្តេជ្ញាចិត្តធ្វើអំពើនោះ។

៤-បោះបង់វាដោយអសមត្ថភាពជាមួយនឹងការប្រើមធ្យោបាយដើម្បីសម្រេចអំពើនោះ។ ក៏ប៉ុន្តែ ក៏ពុំបានសម្រេចតាមបំណងនោះទេ។ បែបនេះគឺគេត្រូវទទួលបាបកម្មពេញទីតែម្តង។ ពីព្រោះការប្តេជ្ញាចិត្តប្រព្រឹត្តរបស់គេនឹងទៅតាមគន្លងនៃអ្នកប្រព្រឹត្តដែរដូចមានចែងក្នុងហាទីសខាងលើ។ ដរាបណាទង្វើព្រមជាមួយនឹងការតាំងចិត្តគឺគេនឹងដាក់ទារុណកម្ម ហើយគេនឹងដាក់ទារុណកម្មផងដែរចំពោះការតាំងចិត្តនេះផង ដ្បិតគេមិនបានប្រព្រឹត្តសាជាថ្មីក៏ដោយ។

- **តទៅនេះគឺជាការប្រតិបត្តិផ្លូវចិត្តខ្លះ**
- ការតាំងចិត្ត(នៀត) បានសេចក្តីថាប៉ងប្រាថ្នា ហើយរាល់អំពើទាំងឡាយត្រឹមត្រូវ និងគេទទួលយកដោយសារការតាំងចិត្តនេះ។ រ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា៖ មានន័យថា៖ **ប្រាកដណាស់ រាល់អំពើទាំងឡាយអាស្រ័យនឹងការតាំងចិត្ត-នៀត- ហើយសម្រាប់បុគ្គលម្នាក់ៗទទួលបានការតាមការនៀតរបស់គេ។ អិបនូ មូហ្ពារីក បាននិយាយថា ជួនកាលអំពើតូចមួយអាចក្លាយជាច្រើនដោយការនៀត ហើយជួនកាលអំពើច្រើនអាចក្លាយជាតូចក៏ដោយសារនៀតដែរ)។**(អាល់ពូខរី និងមូស្លីម)

អាល់ហ្វហ្វេល បាននិយាយថា តាមពិត អល់ឡោះចង់បានការនៀតរបស់អ្នកនិងសេចក្តីប្រាថ្នារបស់អ្នក)។ បើសិនជាអំពើអ្វីមួយសម្រាប់ អល់ឡោះ គេហៅថា អៀខឡើស(ស្មោះត្រង់) គឺតម្រូវឱ្យអំពើនោះសម្រាប់ អល់ឡោះ តែមួយគត់ គ្មានចំណែកសម្រាប់អ្នកផ្សេងក្រៅពីទ្រង់ឡើយ។ បើសិនជាអំពើនេះសម្រាប់អ្នកផ្សេងក្រៅពីទ្រង់នោះគេហៅថារីយ៉ាក់ ឬនីហ្វាក ឬផ្សេងៗទៀត។

**ខ្លឹមសារ:** មនុស្សទាំងអស់ត្រូវវិនាស លើកលែងតែអ្នកចេះដឹង។ ហើយអ្នកចេះដឹងទាំងអស់ត្រូវវិនាស លើកលែងតែអ្នកប្រតិបត្តិ។ ហើយអ្នកប្រតិបត្តិទាំងអស់ត្រូវវិនាស លើកលែងតែអ្នកមានចិត្តអៀខឡើស(សទ្ធាជ្រះថ្លា)។ ដូច្នេះ ភារកិច្ចសំខាន់ទី១ គឺគ្រប់បុគ្គលដែលចង់គោរពប្រតិបត្តិចំពោះ អល់ឡោះ ត្រូវរៀនឱ្យយល់អំពីនៀត បន្ទាប់មកកែប្រែនៀតឱ្យល្អដោយការប្រតិបត្តិ បន្ទាប់ពីបានយល់ពីខ្លឹមសារនៃភាពស្មោះត្រង់និងអៀខឡើស។ ការប្រតិបត្តិដែលគ្មាននៀតគឺនឿយហត់ទទេ ហើយនៀតដែលមិនអៀខឡើសគឺរីយ៉ាក ហើយអៀខឡើសដោយគ្មានការប្រតិបត្តិជាក់ស្តែងគឺជំនឿឥតន័យ។

**អំពើមានបីប្រភេទ: ១-**អំពើបទល្មើស នៀតល្អក្នុងអំពើបទល្មើស។ គឺគេមិនចាត់



ទុកជាការប្រតិបត្តិដែលមានបំណងល្អនោះទេ។ លើសពីនេះ បើសិនជាគេមានបំណងអាក្រក់គឺនឹងត្រូវទទួលបាបកម្មទ្វេដង។

២-ការប្រតិបត្តិគឺវាជាប់ពាក់ព័ន្ធ នឹងការនៀត និងជាឫសគល់នៃភាពត្រឹមត្រូវនិងទទួលបានផលបុណ្យទ្វេដង[1]។ បើសិនជាគេនៀតរីយ៉ាកគឺអំពើរបស់គេក្លាយជាបទល្មើសនិងស្ទីរិកតូច ហើយអាចក្លាយជាស្ទីរិកធំ។ វាមានបីផ្នែក៖

១-កត្តាដែលជំរុញឱ្យគេប្រតិបត្តិអ៊ីហ្លាហ្វាត់ដោយសារខ្សែភ្នែករបស់មហុស្ស

[1] រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ នរណាមានបំណងចង់ធ្វើអំពើល្អ ហើយគេពុំបានធ្វើ អល់ឡោះ កត់ត្រាផលបុណ្យ១ពេញលេញសម្រាប់គេនៅចំពោះទ្រង់។ បើសិនជាគេមានបំណងធ្វើ ហើយគេធ្វើវា។ គឺ អល់ឡោះ កត់ត្រាសម្រាប់គេនៅចំពោះទ្រង់ផលបុណ្យចំនួន១០កើនទៅជា៧០០កើនទ្វេដងរហូត។ ចំពោះនរណាមានបំណងចង់ធ្វើអំពើអាក្រក់ ហើយគេមិនបានធ្វើ អល់ឡោះកត់ត្រាសម្រាប់គេនៅចំពោះទ្រង់ផលបុណ្យ១ពេញលេញ។ បើសិនជាគេមានបំណង ហើយគេធ្វើអំពើអាក្រក់នោះ អល់ឡោះ កត់ត្រាសម្រាប់គេផលបាបតែមួយគត់។ (អាល់ពូខរី និងមូស្លីម) រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ អូម៉ាត់ នេះប្រៀបដូចជាបុរសបួននាក់ បុរសម្នាក់អល់ឡោះប្រទានទ្រព្យសម្បត្តិនិងចំណេះដឹង។ គេប្រើប្រាស់ទ្រព្យសម្បត្តិតាមចំណេះដឹងរបស់គេ។ គេចំណាយតាមច្បាប់របស់វា។ បុរសម្នាក់ទៀត អល់ឡោះ ប្រទានចំណេះដឹង តែមិនប្រទានទ្រព្យសម្បត្តិដល់គេ។ គេនិយាយថាបើសិនជាខ្ញុំមានទ្រព្យ ខ្ញុំនឹងធ្វើដូចបុរសទី១ដែរ។ រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា ពួកគេទាំងពីរនាក់ទទួលបានផលបុណ្យដូចគ្នា។ បុរសម្នាក់ទៀត អល់ឡោះ ប្រទានទ្រព្យសម្បត្តិ តែមិនប្រទានចំណេះដឹង គេងប់ងុលនឹងទ្រព្យសម្បត្តិ។ គេមិនចំណាយតាមច្បាប់របស់វា។ រីឯបុរសម្នាក់ទៀត អល់ឡោះ មិនប្រទានទាំងចំណេះដឹង ទាំងទ្រព្យសម្បត្តិ។ គេនិយាយថាបើសិនជាខ្ញុំមានដូចគេ ខ្ញុំនឹងធ្វើដូចគេដែរ។ រ៉ស៊ូលុឡោះ បានមានប្រសាសន៍ថា ពួកគេទាំងពីរមានបាបកម្មដូចគ្នា។(អាត់តៀរមីហ្ស៊ី) សម្ដីអ្នកទី២និងអ្នកទី៣ក្នុងហាទីសគេតបស្នងតាមលទ្ធភាពគឺការនៀតនិងការប្រាថ្នា ហើយលាតត្រដាងដោយសម្ដីរបស់គេថា(បើសិនជាជាខ្ញុំមានដូចគេ ខ្ញុំនឹងធ្វើដូចគេដែរ)។ ដូច្នេះ ម្នាក់ៗទទួលបុណ្យនិងបាបតាមការប្រាថ្នាចង់បានរបស់គេ។ អិបនូ រ៉ហ្ជាប់ បាននិយាយពាក់ព័ន្ធនឹងខ្លឹមសារហាទីស(ពួកគេទាំងពីរនាក់ទទួលបានផលបុណ្យដូចគ្នា) ជាភស្តុតាងបញ្ជាក់ពីភាពស្មើគ្នានៃការទទួលផលបុណ្យគោល មិនមែនការបន្ថែមទ្វេដងនោះទេ។ ការបន្ថែមទ្វេដងគឺសម្រាប់ចំពោះតែអ្នកដែលបានធ្វើអំពើនោះ។ ឯអ្នកដែលនៀត ហើយពុំបានធ្វើអំពើនោះ បើសិនជាគេទាំងពីរទទួលបានការបន្ថែមផលបុណ្យទ្វេដងស្មើគ្នាទោះក្នុងរូបភាពអ្វីក៏ដោយ គឺផ្ទុយនឹងភស្តុតាងទាំងឡាយដែលបានចែង។




ហើយនេះគឺជាស្ទីរិកនិងអ៊ីហ្លាហ្វាត់នេះក្លាយជាអសារបង់។

២-ដំបូងឡើយអំពើនោះធ្វើដើម្បី អល់ឡោះ តែក្រោយមកត្រូវនៀតរីយ៉ាកជ្រៀតចូល បើសិនជាការប្រតិបត្តិនោះផ្អែកខាងក្រោយមិពឹងលើផ្អែកខាងដើមទេដូចការធ្វើសហ្លាកោះ គឺខាងដើមវាចាត់ទុកថាត្រឹមត្រូវ និងបានការ ហើយខាងចុងវាត្រូវខូច។ តែបើសិនជាខាងក្រោយវាពឹងផ្អែកលើខាងដើមដូចជាសឡាតគឺមានពីរករណី :

ក- ត្រូវរុញច្រានចិត្តរីយ៉ាកនោះចេញ គឺវាមិនប៉ះពាល់ដល់អំពើនោះទេ។

ខ-បើសិនជាគេស្កប់ចិត្តនឹងរីយ៉ាកនោះ គឺការប្រតិបត្តិរបស់គេក្លាយជាអសារបង់ទាំងស្រុងតែម្តង។

៣-មានចិត្តរីយ៉ាកក្រោយពេលធ្វើ នេះគឺការរំខាន ពុំមានផលប៉ះពាល់អ្វីដល់អំពើនោះហើយក៏គ្មានផលប៉ះពាល់ដល់អ្នកធ្វើដែរ។ មានច្រកជាច្រើនសម្រាប់រីយ៉ាកមើលមិនឃើញ។ ដូច្នេះ ចាំបាច់ត្រូវស្គាល់វាហើយប្រុងប្រយ័ត្នពីវា។

រីឯចំពោះអ្នកដែលធ្វើអំពើល្អក្នុងបំណងចង់បានប្រយោជន៍លោកិយ ដូច្នេះ ផលបុណ្យនិងបាបវាអាស្រ័យលើនៀតរបស់គេ ហើយមានបីករណី :

១- កត្តាដែលជំរុញឱ្យគេធ្វើអំពើល្អនោះដោយសារប្រយោជន៍លោកិយតែប៉ុណ្ណោះ ដូចជាអ្នកធ្វើអ៊ីម៉ាំសឡាតដើម្បីចង់បានលុយ គឺអ្នកនោះនឹងទទួលបាបកម្ម។ រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **នរណាស្វែងរកចំណេះដឹងដែលគេរៀនដើម្បី អល់ឡោះ ជាម្ចាស់ គេស្វែងរកគ្មានបំណងអ្វីក្រោយពីចង់បានផលប្រយោជន៍លោកិយ គឺគេនឹងមិនបានធុំក្លិនឋានសួគ៌នោះទេនៅថ្ងៃគីយ៉ាម៉ះ។**(អាពូទើវ៉ូទ)

២-គេធ្វើដើម្បី អល់ឡោះ និងដើម្បីផលប្រយោជន៍ គឺជំនឿនិងចិត្តអៀខឡើសរបស់គេខ្វះចន្លោះ។ ដូចជាអ្នកដែលទៅធ្វើបុណ្យហ៍ជ្ជដើម្បីរកស៊ី ហើយបុណ្យហ៍ជ្ជការប្រតិបត្តិដែលទទួលបានផលបុណ្យអាស្រ័យតាមចិត្តអៀខឡើស។

៣-ធ្វើដើម្បី អល់ឡោះ តែមួយគត់ ក៏ប៉ុន្តែគេយកកម្រៃដែលជួយជំរុញដល់ការងាររបស់គេ។ គេទទួលបានផលបុណ្យពេញលេញមិនខាតបង់អ្វីទេ។ រ៉ស៊ូលុឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **អ្វីដែលពួកអ្នកស័ក្តិសមនឹងយកកម្រៃបំផុតគឺគម្ពីររបស់ អល់ឡោះ។**(អាល់ពូខរី)

ចូរជ្រាបចុះថា! អ្នកដែលធ្វើដោយចិត្តស្មោះសរមានច្រើនកម្រិត :

កម្រិតទាប គឺប្រតិបត្តិដោយប្រាថ្នាចង់បានផលបុណ្យឬខ្លាចត្រូវទារុណកម្ម។

កម្រិតមធ្យម ប្រតិបត្តិដោយការដឹងគុណចំពោះ អល់ឡោះ ឆ្លើយតបនឹងបទបញ្ជារបស់ទ្រង់។ កម្រិតខ្ពស់ ប្រតិបត្តិដោយសេចក្តីស្រឡាញ់ លើកតម្កើង និងគោរព





កោតខ្លាចចំពោះ អល់ឡោះ គឺជាកម្រិតនៃពួកអ្នកដែលស្មោះត្រង់ (الصديقين)[1]។ **តាវហ្ពាត់** ជាកាតព្វកិច្ចត្រូវប្រតិបត្តិជានិច្ច ហើយធម្មជាតិរបស់មនុស្សគឺតែងធ្លាក់ខ្លួនក្នុងចំពើបាប។ រ៉សូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **រាល់មនុស្សលោកទាំងអស់តែងតែមានកំហុស ហើយពួកអ្នកមានកំហុសដែលប្រសើរជាងគេគឺពួកអ្នកដែលតាវហ្ពាត់(ទទួលសារភាពកំហុស)។** (អាតទៀរមីហ្ស៊ី)
រ៉សូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **បើសិនជាពួកអ្នកមិនធ្វើខុសទេ អល់ឡោះ នឹងបំផ្លាញពួកអ្នក ហើយទ្រង់នឹងនាំពួកអ្នកផ្សេងមក ពួកគេធ្វើខុស ហើយពួកគេសុំអភ័យទោសចំពោះ អល់ឡោះ។ ទ្រង់អភ័យទោសចំពោះពួកគេ។** (មូស្លីម)

**ការពន្យារតាវហ្ពាត់ ហើយតាំងចិត្តធ្វើអំពើបាបគឺជាកំហុសធ្ងន់។ ស្ហៃតនចង់ឈ្នះមនុស្សដោយឧបសគ្គចំនួនប្រាំពីរ បើសិនជាវាមិនអាចជម្នះឧបសគ្គមួយគឺគេនឹងផ្លាស់ទៅកាន់ឧបសគ្គមួយទៀត។**

**ទី១** ឧបសគ្គស្ហ៊ីរិកនិងគូហ្វូរ។ **ទី២** បើសិនជាគេមិនអាចគឺអំពើពិដអេះក្នុងជំនឿ ហើយបោះបង់ការប្រកាន់តាមណាពីនិងសហាហ្ពាត់របស់គាត់។
**ទី៣** បើសិនជាគេមិនអាចគឺដោយការធ្វើអំពើបាបកម្រិតធ្ងន់។
**ទី៤** បើសិនជាគេមិនអាចគឺដោយការប្រព្រឹត្តអំពើបាបកម្រិតស្រាល។
**ទី៥** បើសិនជាគេមិនអាចគឺដោយបង្កើតការធ្វើអំពើដែលហារ៉ូស(គេអនុញ្ញាត)។
**ទី៦** បើសិនជាគេមិនអាចគឺដោយការប្រតិបត្តិដែលផ្សេងពីការប្រតិបត្តិដែលល្អប្រសើរនិងទទួលផលបុណ្យធំបំផុត។
**ទី៧** បើសិនជាគេមិនអាច គឺដោយប្រើអំណាចនៃស្ហៃតនជិននិងមនុស្ស។

---

[1] អល់ឡោះបានបន្ទូលថា ﴿وَعَجِلْتُ إِلَيْكَ رَبِّ لِتَرْضَىٰ﴾ មានន័យថា **(ហើយខ្ញុំបានរួសរាន់មកជួបនឹងទ្រង់ ដើម្បីឱ្យទ្រង់បន្ថែមការស្រឡាញ់ និងការយល់ព្រមឱម្ចាស់របស់ខ្ញុំ)** (តហ៊ើ ៨៤)។ ណាពីមូសាយកចិត្តទុកដាក់ក្នុងការប្រញាប់ទៅកាន់អល់ឡោះដើម្បីឱ្យទ្រង់សព្វព្រះទ័យចំពោះគាត់ ហើយគាត់មិនត្រឹមតែឆ្លើយតបនឹងបទបញ្ជារបស់ទ្រង់ប៉ុណ្ណោះទេ។ ដូចគ្នាដែរការកតញ្ញូចំពោះឪពុកម្តាយ។
**កម្រិតទាប** គឺអ្នកធ្វើល្អព្រោះខ្លាចត្រូវទារុណកម្មអំពើអកតញ្ញូ ហើយប្រាថ្នាចង់បានផលបុណ្យនៃអំពើកតញ្ញូ។ **កម្រិតជម្យម** គឺអ្នកធ្វើល្អចំពោះឪពុកម្តាយដោយសារចង់សងគុណដែលលោកទាំងពីរធ្លាប់មានគុណលើអ្នក ចិញ្ចឹមបីបាច់ថែរក្សាអ្នក ហើយលោកទាំងពីរជាមូលហេតុនៃកំណើតរបស់អ្នកមកក្នុងលោកនេះ។ **កម្រិតខ្ពស់បំផុត** គឺកតញ្ញូចំពោះលោកទាំងពីរជាការលើកតម្កើងបទបញ្ជារបស់អល់ឡោះឱ្យអ្នកកតញ្ញូនិងស្រឡាញ់ចំពោះគាត់ទាំងពីរ ហើយជាការលើកតម្កើងចំពោះអល់ឡោះ។




**អំពើម៉ាក់សៀត(បទល្មើស)មានច្រើនប្រភេទ**

១-អំពើបាបកម្រិតធ្ងន់គឺអ្វីដែលត្រូវដាក់ទោសទណ្ឌនៅលើឌុនយ៉ានេះឬត្រូវគំរាមកំហែងនៅថ្ងៃបរលោក ឬត្រូវគេខឹងសម្បា ឬត្រូវដាក់បណ្តាសា ឬបដិសេធនឹងជំនឿ។

២-អំពើបាបកម្រិតស្រាល គឺរាល់អំពើបាបដែលទាបជាងកម្រិតធ្ងន់។ មានមូលហេតុផ្សេងៗដែលធ្វើឱ្យអំពើបាបកម្រិតស្រាលក្លាយជាកម្រិតធ្ងន់ ហើយមូលហេតុដែលសំខាន់បំផុតគឺការតាំងចិត្តធ្វើអំពើបាបកម្រិតស្រាល ឬធ្វើដដែល ឬមើលស្រាល ឬមានមោទនភាពនឹងអំពើបាបកម្រិតស្រាល ឬធ្វើដោយបើកចំហ។

តាវហ្ពាត់ធ្វើបានចំពោះគ្រប់អំពើបាបទាំងអស់ ហើយការតាវហ្ពាត់នេះនៅបិតបេរហូតដល់ថ្ងៃរះពីទិសខាងលិច ឬដង្ហើមចង្រិតពេលជិតស្លាប់។ ផលតបស្នងសម្រាប់អ្នកតាវហ្ពាត់ បើសិនជាមានចិត្តស្មោះត្រង់ក្នុងការតាវហ្ពាត់របស់គេ គឺគេប្តូរអំពើអាក្រក់ទៅជាល្អ ហើយជាអំពើអាក្រក់នោះច្រើនដូចពពកនៅលើមេឃ។

**<u>ដើម្បីឱ្យគេទទួលយកតាវហ្ពាត់គឺមានច្រើនលក្ខខណ្ឌ</u>**

១- បោះបង់ចោលអំពើបាប។ ២- ស្តាយក្រោយចំពោះអ្វីដែលកន្លងហួស។

៣- ប្តេជ្ញាចិត្តយ៉ាងជាក់លាក់មិនត្រឡប់ទៅប្រព្រឹត្តអំពើបាបនៅពេលអនាគត។ បើសិនជាអំពើបាបនោះពាក់ព័ន្ធនឹងសិទ្ធិរបស់មនុស្សលោកគឺចាំបាច់ត្រូវធ្វើសងវិញដល់ជនរងគ្រោះ[1]។

**នៅក្នុងការតាវហ្ពាត់ មនុស្សបែងចែកជាបួនប្រភេទ** ១-បុគ្គលដែលតាវហ្ពាត់ ហើយប្រកាន់ខ្ជាប់នឹងការតាវហ្ពាត់នេះរហូតដល់អាយុចុងក្រោយរបស់គេ។ មិនដែលនឹកក្នុងចិត្តចង់ត្រឡប់ទៅប្រព្រឹត្តអំពើបាបនោះវិញឡើយ។ លើកលែងតែកំហុសដែលមនុស្សមិនអាចចៀសផុត។ ការប្រកាន់ខ្ជាប់នេះគឺជាការតាវហ្ពាត់។ បុគ្គលដែលតា

---

[1] រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា មានន័យថា «**កំណត់ត្រានៅចំពោះ អល់ឡោះ មានបីប្រភេទ។ កំណត់ត្រាមួយ ទ្រង់មិនខ្វល់ រីឯកំណត់ត្រាមួយទៀតគឺទ្រង់មិនចោលអ្វីទាំងអស់ ហើយកំណត់ត្រាចុងក្រោយគឺ អល់ឡោះ មិនអភ័យទោសឱ្យជាដាច់ខាត។ ឯចំណែកកំណត់ត្រាដែល អល់ឡោះ មិនអភ័យទោសឱ្យគឺការស្ហ៊ីរិកចំពោះ អល់ឡោះ។ ទ្រង់បានបន្ទូលថាពិតណាស់ នរណាស្ហ៊ីរិកចំពោះ អល់ឡោះ គឺ អល់ឡោះ ហាមឃាត់ស្ហ្ពគ៌ចំពោះគេ ហើយទីអាស្រ័យរបស់គេគឺឋាននរក)។ រីឯកំណត់ត្រាដែល អល់ឡោះ មិនខ្វល់គឺមនុស្សប្រព្រឹត្តអំពើអយុត្តិធម៌ចំពោះខ្លួនឯងរវាងរូបគេនឹង អល់ឡោះ។ ពិតណាស់ អល់ឡោះ អភ័យទោសឱ្យនិងលើកលែងបើសិនជាទ្រង់សព្វព្រះទ័យ។ រីឯកំណត់ត្រាដែលទ្រង់មិនចោលអ្វីទាំងអស់ គឺការប្រព្រឹត្តអំពើអយុត្តិចំពោះមនុស្សដូចគ្នាគឺត្រូវសងវិញដោយគ្មានករណីលើកលែង)។ (អះម៉ាត់ ហើយនៅក្នុងវាគឺខ្សោយ)**




វហ្គាត់បែបនេះគឺតែងប្រជែងធ្វើអំពើល្អឱ្យបានមុនគេ។ តាវហ្គាត់នេះគេហៅថាតាវហ្គាត់ណាស៊ូហា។ នេះគឺជាចិត្តដែលស្ងប់ស្ងប់ស្ងាត់(النفس المطمئنة)។
២-បុគ្គលដែលតាវហ្គាត់ និងប្រកាន់ខ្ជាប់តែការប្រតិបត្តិសំខាន់ៗ។ ក៏ប៉ុន្តែ គេចៀសមិនផុតពីអំពើបាបដែលខ្លួនគេត្រូវប្រទះ មិនមែនដោយចេតនា។ គេត្រូវ អល់ឡោះសាកល្បងនឹងអំពើបាបនេះដោយពុំបានប្តេជ្ញាចិត្តធ្វើ។ រាល់ពេលដែលខ្លួនប្រព្រឹត្តគេតែងបន្ទោសខ្លួនឯង។ គេសោកស្តាយ ហើយប្តេជ្ញាចៀសវាងពីរាល់មូលហេតុទាំងឡាយនៃអំពើបាប។ នេះគឺជាចិត្តដែលតែងតែបន្ទោសខ្លួនឯង (النفس اللوامة)។
៣- បុគ្គលដែលតាវហ្គាត់ ហើយប្រកាន់បានខ្ជាប់ខ្លួនមួយរយៈកាល។ បន្ទាប់មកត្រូវចាញ់អំណាចតណ្ហាក្នុងអំពើបាបខ្លះ ហើយគេធ្វើអំពើនោះ។ នេះដោយអំណាចតណ្ហាបង្ខំគេ។ លុះគេធ្វើរួច គេស្តាយក្រោយ។ ក៏ប៉ុន្តែ គេសន្យានឹងខ្លួនឯងថានឹងតាវហ្គាត់អំពីអំពើបាបនេះ។ នេះគឺជាចិត្តទទួលខុសត្រូវ (النفس المسؤولة)។ លទ្ធផលវាគឺគ្រោះថ្នាក់បំផុត បើសិនជាគេពន្យារពេលនិងបង្អែបង្អង់ការតាវហ្គាត់។ ជួនកាលគេអាចស្លាប់មុននឹងតាវហ្គាត់។ រាល់អំពើទាំងឡាយវាអាស្រ័យនឹងលទ្ធផលចុងក្រោយរបស់វា។
៤-បុគ្គលដែលតាវហ្គាត់ និងប្រកាន់ខ្ជាប់ខ្លួនបានមួយរយៈ។ បន្ទាប់មក គេត្រឡប់ទៅប្រព្រឹត្តអំពើបាបយ៉ាងងប់ងុលដោយមិនភ្ញាក់រឭកពីរឿងតាវហ្គាត់ មិនស្តាយក្រោយចំពោះអំពើរបស់ខ្លួន គឺជាចិត្តដែលប្រើឱ្យធ្វើអំពើអាក្រក់( النفس الأمارة بالسوء) បុគ្គលបែបនេះគេខ្លាចត្រូវបញ្ចប់ជីវិតដោយអំពើអាក្រក់។

- **ស្មោះត្រង់** វាគឺជាឫសគល់នៃការប្រតិបត្តិផ្លូវចិត្ត ហើយពាក្យស្មោះត្រង់មានន័យប្រាំមួយយ៉ាង

១- ពាក្យសម្តីស្មោះត្រង់។ ២- បំណងប្រាថ្នាស្មោះត្រង់(អៀខឡើស)
៣- ប្តេជ្ញាចិត្តស្មោះត្រង់។ ៤- ស្មោះត្រង់ក្នុងការគោរពតាមការប្តេជ្ញាចិត្ត។
៥-ស្មោះត្រង់ក្នុងការធ្វើឱ្យអាការៈខាងក្រៅត្រូវនឹងអាការៈខាងក្នុងដូចជាការឃុំសួកក្នុងសឡាត។
៦-ស្មោះត្រង់ក្នុងការសម្រេចបាននូវឋានៈផ្សេងៗនៃសាសនា គឺជាកម្រិតដែលខ្ពស់បំផុតនិងប្រសើរបំផុត។ ដូចជាស្មោះត្រង់ក្នុងការខ្លាច សង្ឃឹម ការតម្កើង ការលះបង់ចិត្តលោភលន់ ការពេញចិត្ត ការពឹងផ្អែកសេចក្តីស្រឡាញ់ និងរាល់ការប្រតិបត្តិផ្លូវចិត្តទាំងឡាយ។ នរណាមានលក្ខណៈស្មោះត្រង់ក្នុងការប្រកាន់ដែលបានលើកឡើងគឺគេជាមនុស្សស្មោះត្រង់ ពីព្រោះគេជាមនុស្សដែលស្មោះត្រង់ជាទីបំផុត។ រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖
មានន័យថា៖ **ចូរពួកអ្នកប្រកាន់ខ្ជាប់នឹងភាពស្មោះត្រង់។ ពិតណាស់ ភាពស្មោះ**





**ត្រង់នឹងនាំទៅកាន់អំពើល្អ ហើយអំពើល្អនាំទៅកាន់ឋានសួគ៌។ បុរសម្នាក់ស្មោះត្រង់រហូត ហើយគេស្វែងរកភាពស្មោះត្រង់ជានិច្ចរហូតដល់គេចារនៅចំពោះ អល់ឡោះ ថាគេជាមនុស្សស្មោះត្រង់។**(អាល់ពូខរី និងមូស្លីម)

បុគ្គលណាដែលកើតមន្ទិលសង្ស័យចំពោះសច្ចភាព ហើយគេបួងសួងសុំពី អល់ឡោះ ដោយស្មោះត្រង់ គ្មានកិលេសតណ្ហាគឺភាគច្រើនគេនឹងទទួលបានសម្រេចដូចប្រាថ្នា។ បើសិនជាគេមិនទទួលបានទេ គឺ អល់ឡោះ ទ្រង់អភ័យទោសឱ្យគេ។ ផ្ទុយនឹងភាពស្មោះត្រង់គឺការកុហកបោកប្រាស់។ ការកុហកដំបូងបង្អស់ចេញពីចិត្តទៅកាន់អណ្តាត ហើយវានឹងបំផ្លាញអណ្តាត បន្ទាប់មកការកុហកនេះទៅកាន់អវយវៈ ហើយវាបំផ្លាញនូវរាល់ការប្រព្រឹត្តរបស់អវយវៈដូចជាវាបានបំផ្លាញអណ្តាត គឺពាក្យសម្តីរបស់គេ។ ដូច្នេះ ការកុហកនេះជ្រាបលើសម្តីរបស់គេ អំពើរបស់គេ ហើយអំពើអាក្រក់ត្រួតត្រាលើខ្លួនរបស់គេ។

- **សេចក្តីស្រឡាញ់**ដោយការស្រឡាញ់ចំពោះ អល់ឡោះ រ៉សូលរបស់ទ្រង់និងពួកអ្នកមានជំនឿ។ សេចក្តីស្រឡាញ់នេះនឹងទទួលបានរសជាតិផ្អែមល្ហែមនៃជំនឿ។ រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **បីប្រការ នរណាមានបីប្រការនេះក្នុងខ្លួន អ្នកនោះនឹងស្គាល់រសជាតិនៃជំនឿ ទីមួយអ្នកដែលស្រឡាញ់អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ខ្លាំងជាងស្រឡាញ់អ្វីៗទាំងអស់។ ទីពីរអ្នកដែលស្រឡាញ់មនុស្សម្នាក់គ្មានហេតុផលអ្វីក្រៅពីស្រឡាញ់ក្នុងនាម អល់ឡោះ។ ទីបីអ្នកដែលស្អប់មិនចង់ក្លាយជាមនុស្សគ្មានជំនឿ(កាហ្វៀរ) បន្ទាប់ពីអល់ឡោះ ទ្រង់បានសង្គ្រោះគេឱ្យរួចផុតពីអំពើនេះ ប្រៀបបីដូចជាស្អប់មិនចង់ឱ្យគេយកទៅបោះក្នុងភ្នក់ភ្លើងដែលកំពុងឆេះ។**(អាល់ពូខរី និងមូស្លីម)

បើសិនជាបណ្តុះនូវរុក្ខជាតិនៃសេចក្តីស្រឡាញ់ក្នុងចិត្ត ហើយស្រោចដោយទឹកស្មោះសរ និងប្រតិបត្តិតាមណាពីគឺនឹងទទួលបានផលច្រើន ហើយផ្តល់ផលយ៉ាងពេញលេញដោយការអនុញ្ញាតពីព្រះជាម្ចាស់របស់វា។ សេចក្តីស្រឡាញ់នេះមានបួនប្រភេទ **១-** ស្រឡាញ់ អល់ឡោះ គឺជាឫសគល់នៃជំនឿ។
**២-** ស្រឡាញ់និងស្អប់ក្នុងនាម អល់ឡោះ គឺជាកាតព្វកិច្ច[1]។

---

[1]និយាយពីការស្រឡាញ់និងស្អប់ចំពោះមនុស្ស(អាល់វ៉ាឡាកនិងអាល់ហ្ពារ៉ក) មានបីប្រភេទ **ក-**អ្នកដែលស្រឡាញ់ស្មោះត្រង់គ្មានចិត្តស្អប់គឺពួកអ្នកមានជំនឿជ្រះថ្លាដូចជាពួកណាពី ពួកអ្នកស្មោះត្រង់ ជាពិសេសគឺណាពីយើងមូហាំម៉ាត់ គ្រួសារគាត់និងសហាហ្ពាត់របស់គាត់។




៣- ស្រឡាញ់ជាមួយនឹង អល់ឡោះ គឺយកអ្នកផ្សេងមករួមជាមួយនឹង អល់ឡោះ ក្នុងសេចក្តីស្រឡាញ់ដែលជាកាតព្វកិច្ច។ ដូចជាការស្រឡាញ់របស់ពួកមូស្ហរីគីន ចំពោះព្រះបដិមារបស់ពួកគេ វាជាឫសគល់នៃអំពើស្ហ៊ីរិក។ សេចក្តីស្រឡាញ់បែបធម្មជាតិ ដូចជាស្រឡាញ់ឪពុកម្តាយ កូនចៅ ចំណីអាហារ... គឺជាសេចក្តីស្រឡាញ់ដែលគេអនុញ្ញាត។ ដើម្បីឱ្យ អល់ឡោះ ស្រឡាញ់អ្នក គឺអ្នកត្រូវលះបង់ការលោភលន់នៅក្នុងលោកិយ។ រ៉សូលុលឡោះ បានមានប្រសាសន៍ថា៖
មានន័យថា៖ **ចូរលះបង់ការលោភលន់ក្នុងលោកិយគឺ** អល់ឡោះ ទ្រង់នឹង

---

ខ- ស្អប់ដាច់ខាតគឺពួកកាហ្វៀរ ពួកមុស្ហរីគីន និងពួកមូណាហ្វីគីន។
គ-ស្រឡាញ់ផងស្អប់ផងគឺពួកអ្នកមានជំនឿដែលប្រព្រឹត្តអំពើបទល្មើស។ ស្រឡាញ់ចំពោះជំនឿដែលគេមាន ហើយស្អប់ចំពោះអំពើបទល្មើសដែលគេប្រព្រឹត្ត។ ការស្រឡាញ់ពួកការហ្វៀរនិងគាំទ្រពួកគេគឺបែងចែកជាពីរប្រភេទ។
១- ស្រឡាញ់ដែលនាំឱ្យខ្ជាត់ព្រាត់ចេញពីឥស្លាមគឺគាំទ្រសាសនារបស់ពួកគេ។
២-គាំទ្រនូវអ្វីដែលច្បាប់ហាម ក៏ប៉ុន្តែមិនចេញពីសាសនានោះទេ។ គឺគាំទ្រកិច្ចការឌុនយ៉ារបស់ពួកគេ គេធ្លាក់ក្នុងភាពស្រពេចស្រពិល ច្របូកច្របល់លាយឡំរវាងការប្រាស្រ័យទំនាក់ទំនងល្អជាមួយនឹងពួកកាហ្វៀរ(ដែលពុំមែនជាសត្រូវធ្វើសង្គ្រាម) និងការស្អប់ពួកគេ ហើយដកខ្លួនចេញពីពួកគេ។ គេត្រូវបែងចែកឱ្យច្បាស់រវាងប្រការទាំងពីរនេះគឺត្រូវផ្តល់ភាពយុត្តិធម៌ និងប្រាស្រ័យល្អជាមួយនឹងពួកគេ។ ពុំមែនជាក្តីស្រឡាញ់ដែលចេញពីចិត្ត។ គេអនុញ្ញាតឱ្យអាណិតអាសូរចំពោះពួកអ្នកកាហ្វៀរដែលទន់ខ្សោយ និយាយពាក្យសម្តីទន់ភ្លន់ជាមួយពួកគេ។ ពិតណាស់ អល់ឡោះ បានបន្ទូលថា៖ ﴿لَّا يَنْهَىٰكُمُ ٱللَّهُ عَنِ ٱلَّذِينَ لَمْ يُقَٰتِلُوكُمْ فِى ٱلدِّينِ وَلَمْ يُخْرِجُوكُم مِّن دِيَٰرِكُمْ أَن تَبَرُّوهُمْ وَتُقْسِطُوٓا۟ إِلَيْهِمْ﴾ មានន័យថា «
អល់ឡោះមិនហាមឃាត់ពួកអ្នកក្នុងការធ្វើល្អ និងផ្តល់ភាពយុត្តិធម៌ចំពោះពួកអ្នកកាហ្វៀរដែលមិនធ្វើសង្គ្រាមជាមួយពួកអ្នកក្នុងរឿងសាសនា ហើយមិនបណ្តេញពួកអ្នកចេញពីផ្ទះសម្បែងរបស់ពួកអ្នក។ ពិតណាស់ អល់ឡោះ ទ្រង់ស្រឡាញ់ព្រះទ័យពួកអ្នកដែលប្រកាន់ខ្ជាប់នូវភាពយុត្តិធម៌។ (អាល់មុមតាហ៊ីណះ ៨) រីឯការស្អប់និងចងសត្រូវជាមួយនឹងពួកគេ វាជារឿងមួយផ្សេងទៀតដែល អល់ឡោះ បង្គាប់បញ្ជាដោយបន្ទូលរបស់ទ្រង់ថា៖﴿يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوا۟ لَا تَتَّخِذُوا۟ عَدُوِّى وَعَدُوَّكُمْ أَوْلِيَآءَ تُلْقُونَ إِلَيْهِم بِٱلْمَوَدَّةِ﴾ មានន័យថា «
ឱ! ពួកអ្នកដែលមានជំនឿ! ចូរកុំយកសត្រូវរបស់យើងនិងសត្រូវរបស់ពួកអ្នកធ្វើជាមិត្តភក្តិដោយពួកអ្នកផ្តល់សេចក្តីស្រឡាញ់ចំពោះពួកអ្នក។(អាល់មុមតាហ៊ីណះ ១)អាចផ្តល់ភាពយុត្តិធម៌ដល់ពួកគេក្នុងការប្រាស្រ័យទាក់ទងគ្នាជាមួយនឹងការស្អប់ខ្ពើមពួកគេ មិនត្រូវស្រឡាញ់ពេញចិត្តចំពោះពួកគេដូចជាទង្វើរបស់រ៉សូលុលឡោះចំពោះពួកជ្វីហ្វនៅម៉ាឌីណះ។




ស្រឡាញ់សព្វព្រះទ័យចំពោះអ្នក។

• **តាវ៉ាក្កាល់(ការប្រគល់ខ្លួន)** គឺការផ្ទេរចិត្តនិងការពឹងផ្អែកចំពោះ អល់ឡោះ ក្នុងការសម្រេចនូវអ្វីដែលខ្លួនប្រាថ្នាចង់បាននិងការរុញច្រានប្រការអាក្រក់ជាមួយនឹងការជឿទុកចិត្តចំពោះ អល់ឡោះ ហើយធ្វើនូវរាល់ហេតុជាបច្ច័យដែលស្រប ច្បាប់។ បោះបង់ការផ្ទេរចិត្តគឺជាការក្បត់នឹងជំនឿតាវហេត ហើយការបោះបង់ហេតុជាបច្ច័យគឺការអសមត្ថភាពនិងបញ្ញាមិនពេញលក្ខណៈ។ កន្លែងនៃតាវ៉ាក្កាល់គឺមុននឹងធ្វើ ហើយវាជាផ្លែផ្កានៃភាពយ៉ាកិនជឿជាក់ ហើយវាមានបីប្រភេទ

១- វ៉ាជិប(កាតព្វកិច្ច) គឺការតាវ៉ាក្កាល់ចំពោះ អល់ឡោះ ក្នុងកិច្ចការអ្វីដែលគ្មានអ្នកណាអាចធ្វើបានក្រៅពី អល់ឡោះ ដូចជាការធ្វើឱ្យជំងឺជា។

២- ហារ៉ាម (បម្រាម) ចែកចេញជាពីរប្រភេទ

១-ស្ទីរិកធំ គឺការពឹងផ្អែកទាំងស្រុងចំពោះហេតុជាបច្ច័យ គឺវាមានឥទ្ធិពលទាំងស្រុងក្នុងការនាំមកនូវប្រយោជន៍និងការរុញច្រានគ្រោះថ្នាក់[1]។

---

[1]តើការយកហេតុជាបច្ច័យនិងការតាវ៉ាក្កាល់មានភាពផ្ទុយគ្នាដែរឬទេ? វាមានច្រើនផ្នែក

១- នាំមកនូវប្រភេទដែលគ្មាន ហើយវាមានបីផ្នែកគឺ

ក-មូហេតុដែលជាក់លាក់ដូចជាការរៀបអាពាហ៍ពិពាហ៍ចង់បានកូន បើសិនជាបោះបង់ហេតុជាបច្ច័យនេះ ហើយចង់បានកូនវាគឺជារឿងឆ្កួត។ នេះពុំមែនជារឿងតាវ៉ាក្កាល់នោះទេ។

ខ- មូលហេតុដែលមិនជាក់លាក់ ក៏ប៉ុន្តែហេតុជាបច្ច័យភាគច្រើនគឺមិនអាចកើតឡើងដូចជាអ្នកដំណើរឆ្លងកាត់វាលខ្សាច់សាហារ៉ាដោយគ្មានស្បៀង។ ទង្វើនេះពុំមែនជាតាវ៉ាក្កាល់នោះទេ ហើយការយកស្បៀងទៅជាមួយគឺជារឿងដែលគេបង្គាប់ត្រៀម។ ពិតណាស់ រ៉សូលុលឡោះ នៅពេលគាត់ចេញដំណើរ គាត់ត្រៀមស្បៀង ហើយជួលអ្នកនាំផ្លូវទៅកាន់ម៉ាឌីណះ។

គ-ហេតុជាបច្ច័យដែលគេគិតស្មានថាជាអ្នកសម្រេចដោយគ្មានភាពសេចក្តីទុកចិត្តជាក់ស្តែង ដូចជាអ្នកដែលខិតខំប្រឹងប្រែងរិះរកគ្រប់មធ្យោបាយដើម្បីទទួលបានផលអ្វីមួយ គឺវាមិនចេញហួសពីការតាវ៉ាក្កាល់នោះទេ។ មិនតែប៉ុណ្ណោះ បោះបង់ការស្វែងរកគឺពុំមែនជាតាវ៉ាក្កាល់នោះទេ។ អូម៉ើរ បាននិយាយថាអ្នកតាវ៉ាក្កាលដែលដាក់គ្រាប់ពូជដាំក្នុងដី ហើយគេតាវ៉ាក្កាល់ចំពោះ អល់ឡោះ។

២- រក្សាអ្វីដែលមានស្រាប់ចំពោះអ្នកដែលមានស្បៀងដែលហាឡាល់ ហើយរក្សាទុក នេះគឺមិនចេញក្រៅពីការតាវ៉ាក្កាល់នោះទេ។ ជាពិសេស បើសិនជាគេមានគ្រួសារ។ ពិតណាស់ណាពីបានលក់ដើមល្មើកុលសម្ព័ន្ធហ្គានីណាទៀរ ហើយគាត់បានត្រៀមស្បៀងសម្រាប់គ្រួសារគាត់រយៈពេលមួយឆ្នាំ(អាល់ពូខរី និងមូស្លីម)។




២.ស្ទីរិកតូច ដូចជាពឹងទៅលើបុគ្គលក្នុងការប្រកបរបរចិញ្ចឹមជីវិត ដោយគ្មានជំនឿលើឥទ្ធិពលឯករាជ្យភាពរបស់បុគ្គលនោះ។ ក៏ប៉ុន្តែពឹងផ្អែកចំពោះគេលើសពីជំនឿថាគេគ្រាន់តែជាមូលហេតុប៉ុណ្ណោះ។
៣-គេអនុញ្ញាតិ គឺផ្ញើរការងារឱ្យអ្នកដទៃធ្វើ និងពឹងផ្អែកលើគេ ដែលការងារនោះគេមានលទ្ធភាពអាចធ្វើបាន ដូចជាការលក់ដូរ។ ក៏ប៉ុន្តែគេមិនអនុញ្ញាតឱ្យនិយាយថា ខ្ញុំតាវ័ក្កាល់ចំពោះ អល់ឡោះ និងចំពោះអ្នក។ តែគេត្រូវនិយាយថា ខ្ញុំផ្ញើរការងារនេះឱ្យអ្នក ឬពឹងអ្នកឱ្យធ្វើការងារនេះ។
**ដឹងគុណ** លេចឡើងនូវឥទ្ធិពលនៃពរជ័យ និងនៀកម៉ាត់របស់ អល់ឡោះ ចំពោះខ្ញុំបម្រើក្នុងចិត្តរបស់គេដោយជំនឿ និងនៅលើអណ្តាតរបស់គេដោយសេចក្តីសរសើរ និងតាមរយៈអវយវៈរបស់គេដោយការធ្វើអ៊ីហ្ពាហ្ពាត់។ គឺប្រាថ្នាសម្រាប់ខ្លួនឯង ហើយការអត់ធ្មត់គឺជាមធ្យោបាយសម្រាប់ក្រៅពីការដឹងគុណ។ ការដឹងគុណប្រព្រឹត្តទៅតាមរយៈចិត្ត អណ្តាត និងអវយវៈ។ ការដឹងគុណមានន័យថា ប្រើប្រាស់នៀកម៉ាត់ក្នុងការគោរពប្រតិបត្តិចំពោះអល់ឡោះ។

- **ការអត់ធ្មត់** គឺបោះបង់ការប្តឹងតវ៉ាឬត្អូញត្អែរពីការឈឺចាប់គ្រោះថ្នាក់ទៅកាន់អ្នកផ្សេងក្រៅពី អល់ឡោះ ហើយការប្តឹងតវ៉ានេះទៅកាន់ អល់ឡោះ ជាម្ចាស់។ អល់ឡោះ ជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖ ﴿إِنَّمَا يُوَفَّى ٱلصَّٰبِرُونَ أَجْرَهُم بِغَيْرِ حِسَابٍ﴾ មានន័យថា៖ **ពិតណាស់ គេនឹងផ្តល់សម្រាប់ពួកអ្នកដែលអត់ធ្មត់នូវផលបុណ្យរបស់ពួកគេដោយពុំអាចគណនាបាន។** (អាស់ហ្សូមើរ ១០)
រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **នរណាអត់ធ្មត់ អល់**

---

៣-បង្ការគ្រោះថ្នាក់ដែលមិនទាន់កើត ការបោះបង់ហេតុជាបច្ច័យក្នុងបង្ការគ្រោះថ្នាក់ពុំមែនជាលក្ខខណ្ឌនៃការតាវ័ក្កាល់ទោះទេ។ ដូចជាពាក់អាវក្រោះ ចងអូដ្ឋនឹងខ្សែ។ តាវ័ក្កាល់ក្នុងបញ្ហានេះគឺពឹងលើអ្នកដែលបង្កមូលហេតុ ពុំពឹងលើហេតុនោះទេ ហើយត្រូវពេញចិត្តនឹងការកំណត់របស់ អល់ឡោះ។
៤- បំបាត់គ្រោះថ្នាក់ដែលបានកើតរួច បែងចែកជាបីផ្នែក
ក-ដាច់ខាតដូចជាទឹកបំបាត់ការស្រេក។ បោះបង់ប្រការបែបនេះពុំមែនជាតាវ័ក្កាល់នោះទេ។
ខ-ស្រពេចស្រពិលដូចជាការដេប់បូបឈាម។ល។ មិនផ្ទុយនឹងតាវ័ក្កាល់ទេ។ ពិតណាស់ រ៉ស៊ូលុលឡោះ បានព្យាបាលជំងឺ ហើយគាត់ប្រើឱ្យគេព្យាបាលផងដែរ។
គ-មូលហេតុដែលមិនពិត ដូចដុតកម្លោចមុខរបួសដើម្បីកុំឱ្យកើតជំងឺ ធ្វើបែបនេះផ្ទុយនឹងភាពពេញលេញនៃតាវ័ក្កាល់។




**ឡោះ នឹងជួយឱ្យគេកាន់តែអត់ធ្មត់ ហើយគ្មានអ្វីដែលគេប្រទានជូននរណាម្នាក់ប្រសើរជាងនិងទូលំទូលាយជាងការអត់ធ្មត់។(អាល់ពូខរី និងមូស្លីម)**
អូមើរ (رضي الله عنه)បាននិយាយថា គេគ្មានសាកល្បងខ្ញុំនឹងអ្វីមួយ លើកលែងតែ អល់ឡោះ ប្រទានឱ្យខ្ញុំនៀកម៉ាត់បួន បើមិនក្នុងសាសនារបស់ខ្ញុំទេ ក៏ធំធេងជាងនោះដែរ។ បើមិនទទួលការពេញចិត្តទេ ក៏សង្ឃឹមផលបុណ្យពីទ្រង់ដែរ។
**ការអត់ធ្មត់មានច្រើនកម្រិត** កម្រិតទាប គឺបោះបង់ការប្តឹងតវ៉ាដោយការមិនពេញចិត្ត។ កម្រិតមធ្យម គឺបោះបង់ការប្តឹងតវ៉ាដោយសេចក្តីពេញចិត្ត។ កម្រិតខ្ពស់គឺការសរសើរដល់ អល់ឡោះ ចំពោះគ្រោះថ្នាក់ដែលបានកើតឡើង។ ចំពោះអ្នកដែលត្រូវគេជិះជាន់ដោយអយុត្តិធម៌ ហើយគេបានបួងសួងដាក់បណ្តាសាចំពោះអ្នកដែលជិះជាន់នោះ គឺគេបានឈ្នះសម្រាប់ខ្លួនឯង និងទទួលបានសិទ្ធិរបស់ខ្លួន តែមានន័យថាគេពុំបានអត់ធ្មត់នោះទេ។
**ការអត់ធ្មត់មានពីរប្រភេទ ១-**ផ្លូវកាយ នេះពុំមែនជាគោលបំណងដែលយើងចង់និយាយនោះទេនៅក្នុងអត្ថបទនេះ។
**២-**ផ្លូវចិត្ត គឺអត់ធ្មត់មិនធ្វើរាល់ចរិតឬកាមកិលេសដែលចង់ប្រព្រឹត្ត និងកត្តាចាំបាច់នៃទំនើងចិត្ត[1]។
អ្វីទាំងអស់ដែលមនុស្សជួបប្រទះនៅក្នុងលោកិយនេះមិនចៀសផុតពីពីរប្រភេទនេះទេគឺ **ក-**អ្វីដែលត្រូវនឹងទំនើងចិត្តរបស់គេ ដូច្នេះគេចាំបាច់ត្រូវអត់ធ្មត់ក្នុងការបំពេញកាតព្វកិច្ចចំពោះ អល់ឡោះ ក្នុងនោះមានការដឹងគុណ មិនត្រូវបង្វែរអ្វីមួយដែលត្រូវចិត្តរបស់គេនោះល្មើសចំពោះ អល់ឡោះ ជាម្ចាស់។
**ខ-**ផ្ទុយនឹងទំនើងចិត្តរបស់គេគឺមានបីផ្នែក **១-**អត់ធ្មត់លើការប្រតិបត្តិចំពោះ អល់ឡោះ ហើយចាំបាច់លើគេត្រូវប្រតិបត្តិនូវហ្វ័រទូទាំងឡាយ ហើយគប្បីប្រតិបត្តិអំពើស៊ូណិត។ **២-**អត់ធ្មត់អំពីការប្រព្រឹត្តល្មើសចំពោះ អល់ឡោះ។ គេចាំបាច់ត្រូវបោះបង់ប្រការហារ៉ាម ហើយគប្បីត្រូវបោះបង់ប្រការមឹករ៉ោះ។
**៣-**អត់ធ្មត់លើការកំណត់លិខិតរបស់ អល់ឡោះ ចាំបាច់ត្រូវសង្កត់អណ្តាតមិន

---

[1]ការអត់ធ្មត់ប្រភេទនេះគឺការអត់ធ្មត់អំពីកាមកិលេសស្រេកឃ្លានចំណីអាហារនិងផ្លូវភេទ។ ការអត់ធ្មត់នេះគេហៅថា ភាពស្អាតស្អំបរិសុទ្ធ។ បើសិនជា អត់ធ្មត់ក្នុងការធ្វើសង្គ្រាមវិញគេហៅថាក្លាហាន។ បើសិនជាអត់ធ្មត់ក្នុងការទប់កំហឹងវិញគឺហៅថាចិត្តអំណត់។ បើសិនជាក្នុងការបិទបាំងកិច្ចការអ្វីមួយគេហៅថាបិទបាំងរឿងអាថ៌កំបាំង។ បើសិនជាអត់ធ្មត់អំពីអ្វីដែលលើសពីការរស់នៅគឺការគេហៅលះបង់ការលោភលន់។ បើសិនជាអត់ធ្មត់លើអ្វីដែលតិចតួចនៃទ្រព្យសម្បត្តិឱនយ៉ាគឺគេហៅសុខចិត្ត។



ប្តឹងតវ៉ា សង្កត់ចិត្តមិនជំទាស់ និងខឹងសម្បាចំពោះការលិខិតកំណត់របស់ អល់ឡោះ។ ទប់ស្កាត់អវយវៈរាងកាយពីការប្រព្រឹត្តអ្វីដែល អល់ឡោះ មិនសព្វព្រះទ័យដូចជាការយំស្រែក ហែកខោ ហែកអាវ ទះកំផ្លៀងខ្លួនឯង។ល។ ហើយគប្បីពេញចិត្តចំពោះអ្វីដែល អល់ឡោះ បានលិខិតកំណត់។

**តើមួយណាប្រសើរជាងអ្នកមានដែលដឹងគុណឬអ្នកក្រដែលអត់ធ្មត់?**

បើសិនជាអ្នកមានចំណាយទ្រព្យក្នុងការគោរពប្រតិបត្តិចំពោះ អល់ឡោះ ឬសន្សំទុកប្រតិបត្តិចំពោះ អល់ឡោះ។ បែបនេះគឺប្រសើរជាងអ្នកក្រ តែបើគេចំណាយភាគច្រើនក្នុងប្រការដែលហារូសគឺអ្នកក្រប្រសើរជាង។ រ៉សូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **អ្នកផ្តល់ចំណីអាហារដែលដឹងគុណគឺមានឋានៈស្មើនឹងអ្នកបួសដែលអត់ធ្មត់។**(អះម៉ាត់)

• **ការពេញចិត្ត**គឺការសុខចិត្តទទួលអ្វីមួយនិងគ្រប់គ្រាន់ ហើយទីតាំងរបស់វាគឺបន្ទាប់ពីកើតអំពើរួច។ ការពេញចិត្តនឹងការលិខិតកំណត់របស់ អល់ឡោះ គឺជាឋានៈខ្ពស់បំផុតនៃអ្នកដែលបញ្ជិតខ្លួនចំពោះ អល់ឡោះ។ វាគឺជាផលនៃសេចក្តីស្រឡាញ់និងការតាវ៉ក្កាល់។ រីឯការទូអាបួងសួងចំពោះ អល់ឡោះ ឱ្យលុបបំបាត់នូវអំពើមឹករ៉ូសទាំងឡាយគឺវាផ្ទុយនឹងសេចក្តីពេញចិត្ត។

• **យូសួក(الخشوع)គឺជាលើកតម្កើង** ការបន្ទាបខ្លួន និងឱនលំទោន។ ហ៊ូហៃរ៉ហ្វ៊ះ បាននិយាយថាចូរប្រុងប្រយ័ត្នយូសួកដែលមានចិត្តពុតត្បុត។ គេសួរគាត់ថា តើអ្វីជាយូសួកដែលមានពុតត្បុត? គាត់ឆ្លើយថា គឺឃើញខ្លួនប្រាណយូសួក តែចិត្តមិនយូសួក។ ហ៊ូហៃរ៉ហ្វ៊ះ បាននិយាយទៀតថា អ្វីដែលពួកអ្នកបាត់បង់ពីសាសនារបស់ពួកអ្នកគឺការយូសួក។ បានសេចក្តីថា អ៊ីហ្គាហ្វាត់ដែលផ្តើមដោយភាពយូសួកគឺទទួលបានផលបុណ្យតាមកម្រិតនៃការយូសួក។ ដូចជាសឡាត ណាពីគាត់បានមានប្រសាសន៍ថាអ្នកដែលសឡាតគ្មានទទួលបានផលអ្វីពីការសឡាតរបស់គេក្រៅពីពាក់កណ្តាល ឬមួយភាគបួន ឬមួយភាគច្រើន ឬមួយភាគដប់ ជួនកាលគ្មានទទួលបានផលអ្វីទាំងអស់ពីការសឡាតរបស់គេដោយសារគ្មានភាពយូសួកទាំងស្រុងតែម្តង។

• **សេចក្តីសង្ឃឹម**គឺសម្លឹងមើលភាពទូលំទូលាយនៃក្តីមេត្តារបស់ អល់ឡោះ ហើយផ្ទុយនឹងសង្ឃឹមគឺអស់សង្ឃឹម។ ការប្រតិបត្តិដែលមានសេចក្តីសង្ឃឹមគឺខ្ពង់ខ្ពស់ជាងភាពកោតខ្លាច។ ពីព្រោះសេចក្តីសង្ឃឹមនេះនឹងបន្សល់នូវគំនិតវិជ្ជមានចំពោះ អល់ឡោះ ហើយទ្រង់បានបន្ទូលថា៖

មានន័យថា **យើងនៅជាមួយនឹងការគិតរបស់ខ្ញុំបម្រើយើងចំពោះយើង។**(មូស្លីម)

សេចក្តីសង្ឃឹមនេះមានពីរកម្រិតគឺ

កម្រិតខ្ពស់ ការធ្វើអំពើល្អនិងការប្រតិបត្តិដែលសង្ឃឹមផលតបស្នងរបស់ អល់ឡោះ។

អាអ៊ីស្ហះ បាននិយាយថាបពិត្ររ៉ស៊ូលុលឡោះ ﴿وَالَّذِينَ يُؤْتُونَ مَا آتَوا وَّقُلُوبُهُمْ وَجِلَةٌ﴾ មានន័យថា (**ហើយពួកអ្នកដែលខំប្រតិបត្តិ ហើយចិត្តរបស់ពួកគេភ័យខ្លាច**) គឺជាអ្នកដែលលួចគេ ហ្សីណា និងផឹកស្រា ហើយគេខ្លាច អល់ឡោះ មែនទេ? គាត់បានឆ្លើយថា នែ! កូនស្រីរបស់អាពូបាកើរ មិនមែនទេ ក៏ប៉ុន្តែពួកគេគឺពួកអ្នកដែលសឡាត បួស ធ្វើសហ្ទាកោះ ហើយពួកគេភ័យខ្លាចគេមិនទទួលយកអំពើល្អរបស់ពួកគេ។ ﴿أُوْلَئِكَ يُسَارِعُونَ فِي الْخَيْرَاتِ﴾ មានន័យថា( **ពួកគេទាំងនោះប្រណាំងប្រជែងគ្នាក្នុងការធ្វើអំពើល្អ)។ (អាត់តៀរមីហ្សី)**

<u>កម្រិតទាប</u> អ្នកដែលប្រព្រឹត្តអំពើបាប ហើយតារហ្គាត់សង្ឃឹមការអភ័យទោសរបស់ អល់ឡោះ។ រីឯអ្នកប្រព្រឹត្តបទល្មើសដែលប្តេជ្ញាចិត្តបោះបង់ដើម្បតារហ្គាត់និងសង្ឃឹមក្តីមេត្តារបស់ អល់ឡោះ គឺជាការប៉ងប្រាថ្នាមិនមែនជាសេចក្តីសង្ឃឹមទេ។ នេះគឺជាប្រភេទដែលគេស្តីបន្ទោស ហើយពីរចំណុចដំបូងគឺគេកោតសរសើរ។ អ្នកមានជំនឿមានពីរប្រការគឺអំពើល្អនិងភាពកោតខ្លាច។ រីឯពួកមូណាហ្វិកគឺមានពីរប្រការដែរគឺអំពើអាក្រក់និងក្តីស្រមៃ។

- **ការខ្លាច**គឺជាទុក្ខកង្វល់ដែលកើតក្នុងចិត្តខ្លាចត្រូវទទួលរងនូវអ្វីដែលខ្លួនមិនពេញចិត្ត។ បើសិនជាអ្វីដែលគេស្អប់នោះកើតឡើងជាក់ស្តែង គឺគេហៅថាភ័យខ្លាច ផ្ទុយនឹងសេចក្តីសុខ។ វាមិនផ្ទុយនឹងសេចក្តីសង្ឃឹម ប៉ុន្តែវាកើតឡើងដោយការភ័យ ហើយសេចក្តីសង្ឃឹមកើតឡើងដោយការប៉ងប្រាថ្នា។ ចាំបាច់ត្រូវតែប្របាច់ចូលគ្នារវាងសេចក្តីស្រឡាញ់ ការខ្លាច និងសេចក្តីសង្ឃឹម។ អិបនូ កៃយិមបាននិយាយថាចិត្តដែលឆ្ពោះទៅកាន់ អល់ឡោះ ប្រៀបដូចជាសត្វបក្សី។ សេចក្តីស្រឡាញ់គឺក្បាលបក្សី ហើយខ្លាច និងសង្ឃឹមប្រៀដូចជាស្លាបទាំងពីររបស់វា។ បើសិនជាការខ្លាចឋិតនៅក្នុងចិត្តគឺវាដុតបំផ្លាញចំណង់តណ្ហា ហើយដេញឱនយ៉ាចេញពីចិត្ត។ <u>ការខ្លាចដែលជាកាតព្វកិច្ចគឺ</u> ការខ្លាចដែលជំរុញឱ្យប្រតិបត្តិប្រការវ៉ាជិប និងបោះបង់ប្រការហារ៉ាម។ ការខ្លាចដែលគប្បីគឺការខ្លាចដែលជំរុញឱ្យប្រតិបត្តិប្រការដែលគប្បីធ្វើ ហើយបោះបង់ប្រការមឹករ៉ូស ហើយវាមានច្រើនប្រភេទគឺ

១-ខ្លាចទីកំបាំងនិងខ្លាចក្នុងនាមជាព្រះ ហើយខ្លាចបែបនេះចាំបាច់ត្រូវឧទ្ទិសចំពោះ អល់ឡោះ តែមួយគត់ ហើយការបង្វែរការខ្លាចបែបនេះទៅកាន់អ្វីផ្សេងក្រៅពី អល់ឡោះ គឺជាអំពើស្ទីរិកធំដូចជាខ្លាចព្រះរបស់ពួកមូស្ទរីគីនធ្វើឱ្យគេមានគ្រោះថ្នាក់ ឬទទួលរងនូវអ្វីដែលខ្លួនស្អប់ខ្ពើម។

២- ខ្លាចដែលហារ៉ាម គឺបោះបង់ ប្រការវ៉ាជិប ឬធ្វើប្រការហារ៉ាមដោយសារខ្លាចមនុស្សដូចគ្នា។




៣- ខ្លាចដែលគេអនុញ្ញាត គឺការខ្លាចបែបធម្មជាតិដូចជាខ្លាចសត្វចចក។ល។

• **បោះបង់ភាពលោភលន់** គឺបង្វែរចិត្តប្រាថ្នាពីអ្វីមួយទៅកាន់អ្វីដែលប្រសើរជាងនោះ។ បោះបង់ការលោភលន់នៅក្នុងលោកិយគឺធ្វើចិត្តនិងខ្លួនប្រាណបានស្រាកស្រាន្ត។ ការចង់បានអ្វីៗនៅក្នុងលោកិយធ្វើឱ្យខ្វល់ខ្វាយនិងកើតទុក្ខ។ ស្រឡាញ់ឱនយ៉ាជាក្បាលម៉ាស៊ីននៃកំហុសឆ្គងទាំងឡាយ។ ផ្ទុយទៅវិញការស្អប់លោកិយជាមូលហេតុនៃការគោរពប្រតិបត្តិ។ ការលះបង់ភាពលោភលន់គឺយកវាចេញពីក្នុងចិត្ត។ ពុំមែនគ្រាន់តែចោលវាចេញពីដៃតែចិត្តនៅជំពាក់នោះទេ។ នេះគ្រាន់តែជាការលះបង់ភាពលោភលន់របស់ពួកអ្នកល្ងង់ខ្លៅតែប៉ុណ្ណោះ។ រ៉ស៊ូលុលឡោះ បានមានប្រសាសន៍ថា៖ មានន័យថា៖ **ទ្រព្យល្អដែលប្រសើរបំផុតគឺសម្រាប់បុគ្គលដែលល្អ។** (អះម៉ាត់)

សម្រាប់អ្នកក្រជាមួយនឹងទ្រព្យសម្បត្តិមានប្រាំសណ្ឋាន។

១-រត់គេចពីទ្រព្យដោយសេចក្តីស្អប់ ហើយចៀសវាងពីផលអាក្រក់និងការរវល់នឹងទ្រព្យ នេះគឺគេថាហ្សាហិត(អ្នកដែលលះបង់ភាពលោភលន់)។

២-សប្បាយរីករាយនឹងការទទួលបានទ្រព្យសម្បត្តិ គេមិនស្អប់ខ្ពើមទ្រព្យរហូតដល់ធ្វើឱ្យគេឈឺចាប់ដោយសារទ្រព្យ។ មនុស្សប្រភេទនេះហៅថាអ្នកដែលរ៉ហ្ទ(ពេញចិត្ត)។

៣-មានទ្រព្យប្រសើរជាងគ្មានទ្រព្យដោយសារគេពេញចិត្តនឹងទ្រព្យសម្បត្តិ ក៏ប៉ុន្តែមិនដល់ថ្នាក់ពុះពារដើម្បីទទួលបានទ្រព្យសម្បត្តិ។ តែបើមានទ្រព្យមកដល់ដោយផ្លូវត្រឹមត្រូវគេទទួលយកដោយភាពរីករាយ។ បើសិនជាត្រូវការភាពនឿយហត់ក្នុងការស្វែងរកគឺគេមិនខ្វល់នោះទេ។ មនុស្សប្រភេទនេះហៅថាអ្នកដែលស្កប់ចិត្ត។

៤-គេបោះបង់ការស្វែងរកទ្រព្យដោយសារគេអសមត្ថភាព បើពុំនោះទេគឺគេប្រាថ្នាចង់បានទ្រព្យខ្លាំងណាស់ បើសិនជាមានឱកាស គេនឹងខំប្រឹងដើម្បីទទួលបានទ្រព្យសម្បត្តិ។ មនុស្សប្រភេទនេះហៅថាមនុស្សលោភលន់។

៥- ត្រូវបង្ខំចិត្តរកទ្រព្យដូចជាមនុស្សអត់ឃ្លាន មនុស្សគ្មានសម្លៀកបំពាក់ អត់អាហារ គឺគេហៅថាមនុស្សដែលទាល់ច្រកត្រូវបង្ខំចិត្តរកលុយ។





# ការសន្ទនាគ្នាដោយសន្តិវិធី

មានបុរសម្នាក់ឈ្មោះ អាប់ឌុលឡោះ បានជួបជាមួយបុរសម្នាក់ទៀតឈ្មោះ អាប់ឌុនណាពី។ អាប់ឌុលឡោះ មិនពេញចិត្តនឹងឈ្មោះនេះទេ ហើយក៏និយាយថា ហេតុអ្វីបានជាគេគោរពអ្នកដទៃផ្សេងពី អល់ឡោះ? បន្ទាប់មក គេបានសួរទៅកាន់ អាប់ឌុនណាពី ដោយពោលថា៖ "តើអ្នកគោរពសក្ការៈអ្វីផ្សេងពី អល់ឡោះ ឬ?" អាប់ឌុនណាពី បានឆ្លើយថា៖ "អត់ទេ ខ្ញុំមិនគោរពអ្នកដទៃក្រៅពី អល់ឡោះ ទេ។ ខ្ញុំជាមូស្លីម ហើយខ្ញុំគោរពសក្ការៈចំពោះ អល់ឡោះ តែមួយគត់។"

អាប់ឌុលឡោះ បាននិយាយថា៖ "ហេតុអ្វីបានជាឈ្មោះនេះស្រដៀងឈ្មោះពួកគ្រិស្ទានដែលបានដាក់ឈ្មោះពួកគេថា អាល់ឌុលម៉ាសៀស អ៊ីចឹង។" វាគ្មានអ្វីចម្លែកនោះទេ។ ពិតណាស់ ពួកគ្រិស្ទានគោរពសក្ការៈចំពោះ អ៊ីសា ហើយអ្នកដែលបានឮឈ្មោះរបស់អ្នក គេគិតថាអ្នកគោរព ណាពីមូហាំម៉ាត់។ នេះមិនមែនជាគោលជំនឿរបស់អ្នកមូស្លីមចំពោះ ណាពី របស់គេទេ។ ប៉ុន្តែ ត្រូវឱ្យគេជឿថា មូហាំម៉ាត់ ជាខ្ញុំរបស់ អល់ឡោះ និងជាអ្នកនាំសាររបស់ទ្រង់។

អាប់ឌុនណាពី បាននិយាយថា៖ "ណាពីមូហាំម៉ាត់ ជាមនុស្សដែលល្អជាងគេ ហើយជាចៅហ្វាយនៃ បណ្តាអ្នកនាំសារទាំងអស់។ យើងដាក់ឈ្មោះបែបនេះចង់បានពរជ័យ និងចង់ស្និទ្ធចំពោះ អល់ឡោះ ដោយឋានៈរបស់ ណាពី នៅចំពោះទ្រង់។ យើងសុំ ណាពី ឱ្យជួយអន្តរាគមន៍តាមរយៈការហៅបែបនេះ។ ចូរកុំឆ្ងល់អី! បងរបស់ខ្ញុំឈ្មោះអាប់ឌុលហូសេន ហើយឪពុករបស់ខ្ញុំឈ្មោះ អាប់ឌុល ជាអ្នកនាំសារ។ នៅសម័យមុន ឈ្មោះទាំងអស់នេះល្បីណាស់ ហើយយើងបានឃើញជីដូនជីតារបស់យើងធ្វើបែបនេះដែរ។ ចូរអ្នកកុំតឹងតែងចំពោះបញ្ហាទាំងនេះអី។ **ពិតណាស់ រឿងនេះស្រួលទេ ហើយសាសនាយើងក៏ស្រួលដែរ។"**

អាប់ឌុលឡោះ បាននិយាយថា៖ "អំពើអាក្រក់នៅជំនាន់ក្រោយនេះខ្លាំងជាងជំនាន់មុនទៅទៀត។ គឺគេសុំពីអ្នកដទៃផ្សេងពី អល់ឡោះ ដែលគ្មានលទ្ធភាពអ្វីសោះលើកលែងតែ អល់ឡោះ សូម្បីតែអ្នកនោះជា ណាពីមូហាំម៉ាត់ក្តី ឬបុគ្គលកុសលធម៌ក្រៅពីគាត់ក្តីដូចជា ហូសេន ឬអ្នកដទៃផ្សេងពីគេទៀត គឺវាខុសពីជំនឿតាវហេត ដែលគេបានប្រើយើង ហើយខុសនឹងអត្ថន័យនៃពាក្យ ***គ្មានទេម្ចាស់ដ៏ពិតប្រាកដ គឺមានតែ អល់ឡោះ*** ។ ខ្ញុំនឹងបង្ហាញអ្នកនូវសំណួរខ្លះៗ ដើម្បីបកស្រាយឱ្យអ្នកដឹងពីកិច្ចការដ៏ធំនេះនិងលទ្ធផលនៃការដាក់ឈ្មោះនេះ ហើយលើកជាឧទាហរណ៍បញ្ជាក់។ គ្មានអ្វីជាគោលបំណងរបស់ខ្ញុំ លើកលែងតែជាប្រការត្រឹមត្រូវពិត និងការអនុវត្តតាម ហើយបកស្រាយពីប្រការខុស និងជៀសវាងពីវា ប្រើគ្នាឱ្យធ្វើអំពើល្អ ហាមឃាត់គ្នាពីប្រការអាក្រក់។ អល់ឡោះ ជា





អ្នកជួយ ហើយជាអ្នកត្រូវគេពឹងពាក់។ គ្មាននរណាមានលទ្ធភាពខ្លាំងក្លាក្រៅពី អល់ឡោះ ដ៏មហាខ្ពង់ខ្ពស់និងមហាធំ។ តែមុននឹងខ្ញុំបកស្រាយ ខ្ញុំសូមលើកពីព្រះបន្ទូលរបស់ អល់ឡោះ មកប្រាប់អ្នកជាមុនសិន៖

﴿ إِنَّمَا كَانَ قَوْلَ الْمُؤْمِنِينَ إِذَا دُعُوا إِلَى اللَّهِ وَرَسُولِهِ لِيَحْكُمَ بَيْنَهُمْ أَن يَقُولُوا سَمِعْنَا وَأَطَعْنَا ﴾ មានន័យថា "**ជាការពិតណាស់ ចម្លើយរបស់អ្នកដែលមានជំនឿនៅពេលដែលគេអំពាវនាវទៅកាន់ អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ដើម្បីកាត់ក្ដីរវាងពួកគេ។ ពួកគេឆ្លើយថា ពួកយើងបានឮ ហើយពួកយើងបានប្រតិបត្តិតាម។**(អាន់នួរ : ៥១)

ទ្រង់បានបន្តទៀតថា៖ ﴿ فَإِن تَنَازَعْتُمْ فِي شَيْءٍ فَرُدُّوهُ إِلَى اللَّهِ وَالرَّسُولِ إِن كُنتُمْ تُؤْمِنُونَ بِاللَّهِ وَالْيَوْمِ الْآخِرِ ﴾ មានន័យថា "**ប្រសិនបើពួកអ្នកខ្វែងគំនិតគ្នាអំពីកិច្ចការអ្វីមួយ ចូរពួកអ្នកត្រឡប់ប្រការនោះទៅរក អល់ឡោះ(គម្ពីរគួរអាន) និងអ្នកនាំសារ (សុណ្ណៈ)។ ប្រសិនបើពួកអ្នកមានជំនឿនឹងថ្ងៃបរលោកមែននោះ។** (អាន់នីសាក: ៥៩)

អាប់ឌុលឡោះ និយាយថា៖ "អ្នកនិយាយថាខ្លួនទទួលស្គាល់ អល់ឡោះ តែមួយ ហើយអះអាងថាគ្មានម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដ គឺមានតែ អល់ឡោះ។ តើអ្នកអាចបកស្រាយពីអត្ថន័យរបស់វាពន្យល់ប្រាប់ខ្ញុំបានទេ?"

អាប់ឌុនណាពី បាននិយាយថា៖ "តាវហេត គឺអ្នកត្រូវជឿថាមាន អល់ឡោះ។ ទ្រង់ជាអ្នកបង្កើតមេឃប្រាំពីរជាន់និងដី។ ទ្រង់ជាអ្នកធ្វើឱ្យរស់ ស្លាប់ និងជាអ្នកចាត់ចែងកិច្ចការពិភពលោកទាំងមូល។ ទ្រង់ជាអ្នកប្រទានលាភសក្ការៈ និងជាអ្នកមហាដឹងនិងមហាខ្លាំង។

អាប់ឌុលឡោះ៖ "ប្រសិនបើទាំងអស់នេះជា តាវហេត ច្បាស់ជា ហ្វៀរឱន និងក្រុមរបស់គេ និង អាពូចាហាល់ ព្រមទាំងអ្នកដទៃទៀតដែលមាន តាវហេត នៅក្នុងខ្លួនរបស់ពួកគេបាត់ទៅហើយ។ ពីព្រោះពួកគេមិនមែនមិនយល់ដឹងពីរឿងទាំងអស់នេះ ដូចពួកមូស្លីមភាគច្រើននោះទេ។ ហ្វៀរឱន ជាអ្នកដែលអះអាងថាខ្លួនជាម្ចាស់ តែគេដឹងនិងជឿជាក់នៅក្នុងខ្លួនរបស់គេថា អល់ឡោះមានទ្រង់ជាអ្នករៀបចំពិភពលោក។ ភស្តុតាងបញ្ជាក់ដោយព្រះបន្ទូលរបស់ទ្រង់ថា៖

﴿ وَجَحَدُوا بِهَا وَاسْتَيْقَنَتْهَا أَنفُسُهُمْ ظُلْمًا وَعُلُوًّا ﴾ មានន័យថា "**ពួកគេបានបដិសេធនឹងវា(មុជីហ្សាត់)ទាំងបំពាន និងក្រអឺតក្រទម ខណៈដែលខ្លួនរបស់គេផ្ទាល់ជឿជាក់យ៉ាងច្បាស់ចំពោះវា។**(អាន់ណាំល៍ : ១៤)

ការទទួលស្គាល់ការពិតបានស្ដែងឡើងនៅពេលដែលគេលង់ទឹក។ តែជាតុពិតនៃ តាវហេតុ ដែលគេបញ្ជូនអ្នកនាំសារមក និងបញ្ចុះគម្ពីរមក ហើយគេធ្វើសង្គ្រាមជាមួយពួកគូរស្ស ដើម្បីតាវហេតនេះ។ គឺជាការគោរពសក្ការៈចំពោះ អល់ឡោះ តែម្នាក់គត់។

ការគោរពសក្ការៈមានន័យថា គ្រប់ប្រការទាំងអស់ដែល អល់ឡោះ ស្រឡាញ់ និងពេញចិត្តទាំងពាក្យសម្តី កាយវិការខាងក្នុងនិងខាងក្រៅ។ ពាក្យថា «إِلَٰهَ» នៅក្នុង «لَا إِلَٰهَ إِلَّا اللهُ» មានន័យថាអ្នកដែលត្រូវគេគោរព មិនគប្បីគោរពសក្ការៈលើកលែងចំពោះទ្រង់តែមួយគត់។

អាប់ឌុលឡោះ៖ តើអ្នកដឹងដែរឬទេ? មូលហេតុអ្វីបានជាគេបញ្ជូនអ្នកនាំសារមកលើផែនដីនេះ ហើយអ្នកដំបូងគេបង្អស់គឺ ណាពីនួស?

អាប់ឌុនណាពី៖ ដើម្បីអំពាវនាវ ពួកមូសរីគីនឱ្យគោរពសក្ការៈចំពោះ អល់ឡោះតែមួយគត់ ហើយបោះបង់ការធ្វើស្ទីរិកចំពោះទ្រង់។

អាប់ឌុលឡោះ៖ តើអ្វីជាមូលហេតុដែលធ្វើឱ្យក្រុមណួហស្ទីរិក?

អាប់ឌុនណាពី៖ ខ្ញុំមិនដឹងទេ!

អាប់ឌុលឡោះ៖ អល់ឡោះ បញ្ជូន ណាពីណួហ
ទៅកាន់ក្រុមរបស់គេដោយសារពួកគេជឿចំពោះកុសលបុគ្គលជ្រុលពេកដូចជា វ័តហ្វូ សូវ៉ាក យ៉ាហ្គូស យ៉ាអូក និង ណឹសរ៉។

អាប់ឌុនណាពី៖ អ្នកចង់មានន័យថា វ័តហ្វូ សូវ៉ាក និងក្រៅពីនោះទៀត ជាឈ្មោះរបស់កុសលបុគ្គល មិនមែនជាឈ្មោះពួកមេកាហ្វៀរមែនទេ?

អាប់ឌុលឡោះ៖ បាទ! ទាំងនេះជាឈ្មោះកុសលបុគ្គល ដែលក្រុមណួហបានយកពួកគេធ្វើជាម្ចាស់ ហើយពួកអារ៉ាប់ក៏ធ្វើបែបនោះតាមពួកគេ។ ភស្តុតាងបញ្ជាក់ពីរឿងនេះគឺ អ៊ិបនូអាប់ពើស បាននិយាយថា៖ "ព្រះនៅសម័យក្រុមណួហបានក្លាយជាព្រះនៅសម័យអារ៉ាប់។ ចំណែកឯរូបបដិមា វ័តហ្វូ សម្រាប់ពួកកុលសម្ព័ន្ធគីលាបនៅដាវម៉ាតុលជុនហ្វាល់។ រីឯ សូវ៉ាក ជាព្រះបដិមាសម្រាប់កុលសម្ព័ន្ធហូហៃ្សល។ យ៉ាហ្គូស ជាព្រះបដិមាសម្រាប់ពួកមូរ៉ត បន្ទាប់មកសម្រាប់ពួកកុលសម្ព័ន្ធហ្គូតៃហ្វនៅស្រុកជ៉ីហ្វនៃទឹកដីសាបាក់។ យ៉ាអូក ជាព្រះបដិមារបស់ពួកហាំដាន។ ចំណែកឯ ណឹសរ៉ ជាព្រះបដិមារបស់ពួកហ៊ិមយើរសម្រាប់ត្រកូល ហ្ស៊ិលកាឡាក។ ទាំងនេះជាឈ្មោះរបស់ពួកកុសលបុគ្គលនៃក្រុមណាពីណួហ។ នៅពេលពួកគេបានស្លាប់ទៅ ស្វៃតន បានប្រាប់ក្រុមរបស់ពួកគេឱ្យឆ្លាក់រូបពួកគេដាក់នៅកន្លែងដែលពួកគេធ្លាប់អង្គុយ ហើយដាក់ឈ្មោះឱ្យពួកគេ។ ពួកគេក៏ធ្វើតាម តែពួកគេមិនទាន់បានគោរពសក្ការៈទេ រហូតដល់អ្នកទាំងនោះបានស្លាប់អស់ ហើយគេអត់បានដឹងពីពួកជំនាន់ក្រោយក៏គោរពសក្ការៈរីវ៉ាយ៉ាត់ អាល់ពូខរីយ៍ ដែរ។

អាប់ឌុនណាពី៖ នេះជាសម្តីគួរឱ្យចាប់អារម្មណ៍!

អាប់ឌុលឡោះ៖ តើអ្នកចង់ឱ្យខ្ញុំប្រាប់អ្នកពីអ្វីដែលអស្ចារ្យជាងនេះទេ ។ អ្នកបានដឹងរួចមកហើយថា ណាពីមូហាំម៉ាត់ ជាណាពីចុងក្រោយគេបង្អស់ដែល អល់



ឡោះ បានបញ្ជូនគាត់មកកាន់ក្រុមមនុស្សដែលសុំការអភ័យទោស គោរពសក្ការៈ តវ៉ាហ្វ ធ្វើសាអ៊ី ធ្វើហាជ្ជ និងបរិច្ចាគទាន។ តែពួកគេបានយកសត្វលោករបស់ទ្រង់ធ្វើជាខ្សែរយៈរវាងពួកគេនឹង អល់ឡោះ។ ពួកគេនិយាយថា យើងចង់ឱ្យពួកគេជួយឱ្យយើងបញ្ជិតខ្លួនចំពោះ អល់ឡោះ និងចង់ឱ្យពួកគេជួយសង្គ្រោះយើងនៅចំពោះមុខ អល់ឡោះ។ ប្រៀបដូចជាទេវតា ណាពីអ៊ីសា និងកុសលបុគ្គលជាច្រើនទៀត។ ដូច្នេះ អល់ឡោះ ក៏ចាត់តាំង ណាពី ឱ្យមកប្រាប់ពួកគេពីសាសនាបិតារបស់ពួកគេ អ៊ីបព្រហ៊ីម ហើយប្រាប់ពួកគេថាការបញ្ជិតខ្លួននិងគោលជំនឿនេះជាសិទ្ធិរបស់ អល់ឡោះ តែមួយគត់។ គ្មានអ្វីស័ក្តិសមក្រៅពីទ្រង់ឡើយ។ ទ្រង់តែមួយគត់ជាអ្នកបង្កើត គ្មានដៃគូសម្រាប់ទ្រង់ឡើយ។ គ្មានអ្នកប្រទានលាភសក្ការៈលើកលែងតែទ្រង់។ អ្វីដែលមាននៅលើមេឃប្រាំពីរជាន់និងផែនដីប្រាំពីរជាន់គឺជាខ្ញុំបម្រើរបស់ទ្រង់ និងស្ថិតនៅក្រោមការចាត់ចែងដោយអំណាចរបស់ទ្រង់។ មិនត្រឹមតែប៉ុណ្ណោះ សូម្បីតែព្រះដែលពួកគេកំពុងតែគោរពក៏ពួកគេទទួលស្គាល់ថាព្រះនោះស្ថិតនៅក្រោមអំណាចនិងការចាត់ចែងរបស់ទ្រង់ដែរ។

**អាប់ឌុនណាពី៖** នេះជាពាក្យសម្តីដ៏សែនគ្រោះថ្នាក់និងគួរឱ្យចាប់អារម្មណ៍។ តើមានភស្តុតាងបញ្ជាក់ពីរឿងនេះទេ?

**អាប់ឌល់ឡោះ៖** ភស្តុតាងមានច្រើន ហើយភស្តុតាងខ្លះមានដូចជា អល់ឡោះបានមានបន្ទូលថា៖

﴿ قُلْ مَن يَرْزُقُكُم مِّنَ ٱلسَّمَآءِ وَٱلْأَرْضِ أَمَّن يَمْلِكُ ٱلسَّمْعَ وَٱلْأَبْصَٰرَ وَمَن يُخْرِجُ ٱلْحَىَّ مِنَ ٱلْمَيِّتِ وَيُخْرِجُ ٱلْمَيِّتَ مِنَ ٱلْحَىِّ
وَمَن يُدَبِّرُ ٱلْأَمْرَ فَسَيَقُولُونَ ٱللَّهُ فَقُلْ أَفَلَا تَتَّقُونَ ﴾

មានន័យថា "ចូរអ្នក(ណាពីមូហាំម៉ាត់)ពោលថា តើនរណាជាអ្នកប្រទានលាភ សក្ការៈដល់ពួកអ្នកពីលើមេឃប្រាំបីជាន់និងផែនដី? ឬអ្នកណាជាម្ចាស់កម្មសិទ្ធិនៃការឮនិងការឃើញ? តើនរណាជាអ្នកបង្កើតរបស់មានជីវិតចេញពីរបស់គ្មានជីវិត? តើនណាជាអ្នកចាត់ចែងកិច្ចការទាំងឡាយ? ពួកគេនឹងឆ្លើយថាគឺ អល់ឡោះ។ ដូច្នេះ ចូរអ្នកសួរថា តើពួកអ្នកមិនកោតខ្លាចទេឬ?(យ៉ូណុះ : ៣១)

ទ្រង់បានបន្តទៀតថា៖

﴿ قُل لِّمَنِ ٱلْأَرْضُ وَمَن فِيهَآ إِن كُنتُمْ تَعْلَمُونَ ﴿٨٤﴾ سَيَقُولُونَ لِلَّهِ ۚ قُلْ أَفَلَا تَذَكَّرُونَ ﴿٨٥﴾ قُلْ مَن رَّبُّ ٱلسَّمَٰوَٰتِ
ٱلسَّبْعِ وَرَبُّ ٱلْعَرْشِ ٱلْعَظِيمِ ﴿٨٦﴾ سَيَقُولُونَ لِلَّهِ ۚ قُلْ أَفَلَا تَتَّقُونَ ﴿٨٧﴾ قُلْ مَنۢ بِيَدِهِۦ مَلَكُوتُ كُلِّ شَىْءٍ وَهُوَ
يُجِيرُ وَلَا يُجَارُ عَلَيْهِ إِن كُنتُمْ تَعْلَمُونَ ﴿٨٨﴾ سَيَقُولُونَ لِلَّهِ ۚ قُلْ فَأَنَّىٰ تُسْحَرُونَ ﴾

មានន័យថា "ចូរអ្នក(ណាពីមូហាំម៉ាត់)ពោលថា តើផែនដីនិងអ្វីៗដែលមាននៅលើវាជាកម្មសិទ្ធិរបស់អ្នកណា? ប្រសិនបើពួកអ្នកបានដឹងមែននោះ។ ពួកគេនឹងឆ្លើយថាវាជាកម្មសិទ្ធិរបស់ អល់ឡោះ តែមួយគត់។ ចូរអ្នកតបវិញថា បើដូច្នេះតើពួកអ្នក




មិនភ្ញាក់រឭកទេឬ? ចូរអ្នកសួរទៀតថា តើអ្នកណាជាម្ចាស់គ្រប់គ្រងមេឃទាំងប្រាំពីរជាន់ និងជាម្ចាស់នៃបល្ល័ង្កដ៏ធំធេងនោះ? ពួកគេនឹងឆ្លើយថា ជាកម្មសិទ្ធិរបស់ អល់ឡោះ តែមួយគត់។ ចូរអ្នកតបវិញថា បើដូច្នោះតើពួកអ្នកមិនកោតខ្លាចអល់ឡោះ ទេឬ? ចូរអ្នកសួរទៀតថា តើអ្នកណាជាអ្នកគ្រប់គ្រងអ្វីៗទាំងអស់ក្នុងកណ្ដាប់ដៃរបស់គេ ហើយគេជាអ្នកការពារ(អ្វីៗទាំងអស់) និងគ្មាននរណាអាចការពារបាន(ពីទារុណកម្មរបស់គេ) ប្រសិនបើពួកគេបានដឹងមែននោះ? ពួកគេនឹងឆ្លើយថា ជាកម្មសិទ្ធិរបស់ អល់ឡោះ តែមួយគត់។ ចូរអ្នកតបថា ដូច្នេះ តើពួកអ្នកត្រូវគេបោកបញ្ឆោត (ឱ្យងាកចេញពីសច្ចភាព)បានយ៉ាងដូចម្ដេច? (អាល់មុមីន : ៨៤-៨៩)

**ពួកមុសរីគីនបានសូត្រតាលពីយ៉ះនៅពេលធ្វើបុណ្យហាជ្ជថា៖** មានន័យថា "**បពិត្រ អល់ឡោះ ជាម្ចាស់សូមឆ្លើយតបនឹងការអំពាវនាវរបស់ទ្រង់ ទ្រង់គ្មានដៃគូ។ លើកលែងតែដៃគូរបស់ទ្រង់ វាសម្រាប់ទ្រង់ ហើយវាគ្មានកម្មសិទ្ធិអ្វីនោះទេ។**"

ពួកមុសរីគីនគូរេស្សបានទទួលស្គាល់ថា អល់ឡោះ ជាអ្នកចាត់ចែងពិភពលោក ឬគេហៅថា តាវហេតរូពូពីយ៉ះ។ តាវហេតនេះពុំធ្វើឱ្យពួកគេចូលឥស្លាមនោះទេ។ ពិតណាស់ គោលបំណងរបស់ពួកគេចង់ឱ្យពួកទេវតាណាពីៗ និងវ៉ាលីៗជួយពួកគេឱ្យបញ្ចិតខ្លួនចំពោះ អល់ឡោះ។ នេះជាកត្តាដែលធ្វើឱ្យជីវិតនិងទ្រព្យសម្បត្តិរបស់ពួកគេក្លាយជាហាឡាល់។ ដូច្នេះ គ្រប់ការសុំទូអាទាំងអស់ត្រូវតែសុំចំពោះ អល់ឡោះ តែមួយគត់។ ការសច្ចាទាំងអស់សម្រាប់ អល់ឡោះ, ការបូជាដើម្បី អល់ឡោះ, សុំជំនួយពី អល់ឡោះ, និងគ្រប់ការគោរពសក្ការៈទាំងអស់សម្រាប់ អល់ឡោះ តែមួយគត់។

អាប់ឌុន់ណាពី៖ បើតាវហេតមិនមែនមានន័យថា ការទទួលស្គាល់ថាមាន អល់ឡោះ ហើយទ្រង់ជាអ្នកចាត់ចែងពិភពលោក ដូចគេអះអាងនោះទេ។ ចុះ វាមានអត្ថន័យយ៉ាងដូចម្ដេច?

អាប់ឌុល់ឡោះ៖ តាវហេតដែលគេចាត់តាំងអ្នកនាំសារមកដើម្បីវា ហើយដែលពួកមុសរីគីនមិនទទួលស្គាល់នោះគឺការគោរពសក្ការៈចំពោះ អល់ឡោះ តែមួយគត់។ មិនត្រូវគោរពសក្ការៈចំពោះអ្នកដទៃផ្សេងពីទ្រង់ឡើយ។ ដូចជាទូអា ការសច្ចា ការសម្លេះ ការសុំទឹកភ្លៀង ការសុំជំនួយ។ល។ នេះជាអត្ថន័យនៃតាវហេតដែលអ្នកនិយាយថា "គ្មានម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដ លើកលែងតែ អល់ឡោះ។" ពិតណាស់ ពួកមុសរីគីនកូរេស្សគិតថាពាក្យ **ព្រះ** គឺសំដៅដល់ការគោរពសក្ការៈទាំងនេះ។ ទោះជាទេវតា ឬណាពី ឬវ៉ាលី ឬដើមឈើ ឬផ្នូរ ឬជិន ពួកគេមិនមែនចង់មានន័យថាព្រះគឺជាអ្នកបង្កើត ជាអ្នកប្រទានលាភសក្ការៈ និងជាអ្នកចាត់ចែងនោះទេ។ តែពួកគេដឹងថា កិច្ចការទាំងអស់នេះសម្រាប់ អល់



ឡោះ តែមួយគត់ដូចបាននិយាយពីមុនមក។
ណាពី បានមកកាន់ពួកគេ ហើយអំពាវនាវពួកគេទៅកាន់តាវហេត «لا إله إلا الله» គ្មានទេម្ចាស់ដែលគេគោរពសក្ការៈដ៏ពិតប្រាកដគឺមានតែ អល់ឡោះ។ ត្រូវអនុវត្តតាមអត្ថន័យរបស់វា មិនមែនត្រឹមតែពោលនឹងអណ្ដាតតែប៉ុណ្ណោះឡើយ។
អាប់ឌន់ណាពី៖ អ្នកចង់និយាយថា ពួកមុស្សរីគីនគួរស្គាល់ដឹងពីអត្ថន័យនៃពាក្យថា គ្មានទេម្ចាស់ដ៏ពិតប្រាកដគឺមានតែ អល់ឡោះ ជាងអ្នកមូស្លីមនៅសម័យយើង។
អាប់ឌល់ឡោះ៖ ពិតមែនហើយ! នេះជារឿងដែលបានកើតឡើងជាក់ស្ដែងគួរឱ្យឈឺចាប់។ ពិតណាស់ ពួកកាហ្វៀរដែលល្ងង់ខ្លៅដឹងពីគោលបំណងរបស់ ណាពី នៃពាក្យទាំងអស់នេះគឺការគោរពសក្ការៈចំពោះ អល់ឡោះ តែមួយគត់ ហើយបដិសេធមិនទទួលស្គាល់អ្វីដែលគេគោរពផ្សេងពី អល់ឡោះ។ នៅពេល ណាពី និយាយទៅកាន់ពួកគេថា ចូរពួកអ្នកសូត្រថា «لا إله إلا الله» គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែ អល់ឡោះ។ ពួកគេនិយាយថា៖ ﴿أَجَعَلَ ٱلْآلِهَةَ إِلَٰهًا وَٰحِدًا ۖ إِنَّ هَٰذَا لَشَىْءٌ عُجَابٌ﴾ មានន័យថា "**តើគេយកព្រះនានាធ្វើជាម្ចាស់តែមួយដើម្បីគោរពសក្ការៈឬ? ពិតណាស់ នេះគឺជាប្រការមួយដែលចម្លែកបំផុត។**(សទ៍ : ៥)
ជាមួយនឹងជំនឿរបស់ពួកគេថា អល់ឡោះ ទ្រង់ជាអ្នកចាត់ចែងពិភពលោក ហើយពួកកាហ្វៀរដែលល្ងង់ខ្លៅដឹងពីរឿងនេះ។ តែគួរឱ្យចម្លែកចំពោះជនដែលអះអាងថាខ្លួនជាឥស្លាម តែបែរជាមិនដឹងពីអត្ថន័យនៃពាក្យទាំងនេះ ដែលពួកកាហ្វៀរបានដឹង។ មិនត្រឹមតែប៉ុណ្ណោះ គេបែរជាគិតថាវាគ្រាន់តែជាការពោលពាក្យពេចន៍របស់វាតែប៉ុណ្ណោះដោយដួងចិត្តមិនចាំបាច់ជឿពីអត្ថន័យរបស់វា។ ពួកអ្នកដែលឈ្លាសវៃក្នុងចំណោមពួកគេគិតថា អត្ថន័យរបស់វាគ្មានអ្នកបង្កើត គ្មានអ្នកប្រទានលាភសក្ការៈ និងគ្មានអ្នកចាត់ចែងកិច្ចការនោះ លើកលែងតែ អល់ឡោះ។ វាមិនល្អទេចំពោះអ្នកដែលអះអាងថាខ្លួនជាអ្នកឥស្លាម តែបែរជាពួកកាហ្វៀរដឹងពីអត្ថន័យនៃពាក្យ «لا إله إلا الله» គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែ អល់ឡោះ ខ្លាំងជាងអ្នកនោះទៅវិញ។
អាប់ឌន់ណាពី៖ តែខ្ញុំមិនធ្វើស្ទីរិកចំពោះ អល់ឡោះ។ លើសពីនេះ ខ្ញុំធ្វើសាក្សីថា គ្មានអ្នកបង្កើត គ្មានអ្នកប្រទានលាភសក្ការៈ គ្មានអ្នកផ្ដល់ជោគវាសនា និងគ្មានអ្នកធ្វើឱ្យមានគ្រោះថ្នាក់គឺមានតែ អល់ឡោះ តែមួយគត់។ គ្មានការចូលហ៊ុនជាមួយទ្រង់ឡើយ។ ពិតណាស់ មូហាំម៉ាត់ ក៏មិនអាចធ្វើឱ្យខ្លួនរបស់គេទទួលបានផល ឬមិនអាចការពារគ្រោះថ្នាក់។ លើសពីនេះដូចជា អាលី ហូសេន អាប់ឌល់កទៀរ និងអ្នកដទៃទៀត។ ក៏ប៉ុន្តែ ខ្ញុំមានកំហុស ហើយពួកកុសលបុគ្គលមានឋានៈនៅចំពោះ អល់ឡោះ ហើយខ្ញុំសុំពីពួកគេឱ្យជួយសង្គ្រោះខ្ញុំនៅចំពោះ អល់ឡោះ





តាមឋានៈរបស់ពួកគេ។

អាប់ឌុលឡោះ៖ ខ្ញុំបានឆ្លើយនឹងអ្នកពីដំបូងរួចហើយ។ ពួកអ្នកដែល ណាពី ធ្វើសង្គ្រាមជាមួយពួកគេ គឺពួកគេទទួលស្គាល់អ្វីដែលអ្នកបានលើកឡើង។ ពួកគេទទួលស្គាល់ថាព្រះរបស់ពួកគេមិនអាចចាត់ចែងអ្វីបានទេ តែពួកគេចង់និយាយពី ឋានៈនិងការជួយសង្គ្រោះ។ ដូចបាននិយាយរួចមកហើយថាភស្តុតាងដែលយើងលើកមកបញ្ជាក់នោះគឺមកពី គួរអាន។

អាប់ឌុនណាពី៖ តែអាយ៉ាត់នេះបញ្ចុះមកចំពោះអ្នកដែលគោរពព្រះបដិមាតែប៉ុណ្ណោះ។ ចុះហេតុម្តេចបានជាពួកអ្នកចាត់ទុកណាពីៗនិងកុសលបុគ្គលដូចរូបបដិមាដែរ?

អាប់ឌុលឡោះ៖ យើងបានឯកភាពគ្នាថារូបចម្លាក់មួយចំនួនត្រូវបានដាក់ឈ្មោះរបស់កុសលបុគ្គលដូចជានៅសម័យណួហ។ ពិតណាស់ ពួកកាហ្វៀរគ្មានបំណងអ្វីក្រៅពីចង់បានការសង្គ្រោះនៅចំពោះ អល់ឡោះ នោះទេ។ ពីព្រោះថាកុសលបុគ្គលមានឋានៈនៅចំពោះ អល់ឡោះ។ ភស្តុតាងគឺព្រះបន្ទូលរបស់ អល់ឡោះថា៖ ﴿وَٱلَّذِينَ ٱتَّخَذُواْ مِن دُونِهِۦٓ أَوۡلِيَآءَ مَا نَعۡبُدُهُمۡ إِلَّا لِيُقَرِّبُونَآ إِلَى ٱللَّهِ زُلۡفَىٰٓ﴾ មានន័យថា "ពួកអ្នកដែលបានយកម្ចាស់ផ្សេងពីទ្រង់(បាននិយាយថា)ពួកយើងមិនគោរពសក្ការៈចំពោះពួកគេទេ លើកលែងតែដើម្បីឱ្យពួកគេបញ្ជិតពួកយើងឱ្យជិតបំផុតចំពោះអល់ឡោះ។ (អាសហ្ស៊ូមើរ : ៣)

**រីឯពាក្យដែលអ្នកថាតើពួកអ្នកចាត់ទុក ណាពីៗ និង វ៉ាលី ដូចរូបចម្លាក់ម្តេចនឹងកើត?**

យើងសូមឆ្លើយថា ពិតណាស់ពួកកាហ្វៀរដែលទ្រង់បានបញ្ជូន ណាពី មកកាន់ពួកគេ អ្នកខ្លះបួងសួងសុំពីពួកវ៉ាលីដែល អល់ឡោះ បានមានព្រះបន្ទូលពីពួកគេថា៖

﴿أُوْلَٰٓئِكَ ٱلَّذِينَ يَدۡعُونَ يَبۡتَغُونَ إِلَىٰ رَبِّهِمُ ٱلۡوَسِيلَةَ أَيُّهُمۡ أَقۡرَبُ وَيَرۡجُونَ رَحۡمَتَهُۥ وَيَخَافُونَ عَذَابَهُۥٓۚ إِنَّ عَذَابَ رَبِّكَ كَانَ مَحۡذُورٗا﴾

មានន័យថា "ពួក(ព្រះនានា)ដែលពួកមុស្ធរីគីននៅបួងសួងសុំនោះ ពួកគេស្វែងរកមធ្យោបាយទៅកាន់ម្ចាស់របស់ពួកគេ។ ពួកគេណាម្នាក់ដែលជិតនឹង អល់ឡោះ បំផុតនោះ។ ពួកគេសង្ឃឹមការប្រោសប្រទានរបស់ទ្រង់ ហើយពួកគេខ្លាចទារុណកម្មរបស់ទ្រង់។ ពិតណាស់ ទារុណកម្មម្ចាស់របស់អ្នកគ្រោះថ្នាក់ជាទីបំផុត។ (អាល់អ៊ីសរ៉ក : ៥៧)

អ្នកខ្លះទៀតបួងសួងសុំអ៊ីសានិងម្តាយរបស់អ៊ីសា។ អល់ឡោះ បានមានព្រះបន្ទូលថា៖ ﴿وَإِذۡ قَالَ ٱللَّهُ يَٰعِيسَى ٱبۡنَ مَرۡيَمَ ءَأَنتَ قُلۡتَ لِلنَّاسِ ٱتَّخِذُونِي وَأُمِّيَ إِلَٰهَيۡنِ مِن دُونِ ٱللَّهِ﴾ មានន័យថា "នៅពេលដែល អល់ឡោះ បានសួរថា ឱអ៊ីសាកូនម៉ារយ៉ាំ! តើអ្នកបាននិយាយទៅ



កាន់មនុស្សលោកថា ចូរពួកអ្នកទទួលយកខ្ញុំនិងម្តាយរបស់ខ្ញុំធ្វើជាម្ចាស់ពីរអង្គក្រៅពី អល់ឡោះ មែនទេ? (អាល់ម៉ាអ៊ីដះ : ១១៦)

**អ្នកខ្លះទៀតបួងសួងសុំចំពោះពួកទេវតា។ អល់ឡោះ បានមានព្រះបន្ទូលថា៖**

﴿وَيَوْمَ يَحْشُرُهُمْ جَمِيعًا ثُمَّ يَقُولُ لِلْمَلَٰٓئِكَةِ أَهَٰٓؤُلَآءِ إِيَّاكُمْ كَانُوا۟ يَعْبُدُونَ﴾ មានន័យថា "នៅថ្ងៃដែលទ្រង់ប្រមូលផ្តុំពួកគេទាំងអស់គ្នា ក្រោយមកទ្រង់មានបន្ទូលទៅកាន់ពួកទេវតាថាតើអ្នកទាំងនោះឬដែលបានគោរពសក្ការៈមកចំពោះពួកអ្នក? (សាពើអ : ៤០)

ចូរពិចារណាអាយ៉ាត់ទាំងនេះ ពិតណាស់ អល់ឡោះ ចាត់ទុកអ្នកដែលលើតម្កើងរូបចម្លាក់ កុសលបុគ្គល ណាពី ទេវតា និងវ៉ាលី គឺជាកាហ្វៀរដូចគ្នា។ ដោយហេតុនេះហើយ បានជាអ្នកនាំសារ អល់ឡោះ បានធ្វើសង្គ្រាមជាមួយពួកគេដោយគ្មានការបែងចែកឡើយ។

អាប់ឌន់ណាពី៖ តែពួកកាហ្វៀរចង់បានអត្ថប្រយោជន៍ពីពួកគេ។ ខ្ញុំសូមធ្វើសាក្សីថា អល់ឡោះ ទ្រង់ជាអ្នកផ្តល់ផលប្រយោជន៍ ជាអ្នកធ្វើឱ្យមានគ្រោះថ្នាក់ និងជាអ្នកចាត់ចែង ខ្ញុំគ្មានចង់បានអ្វីទាំងនោះពីនរណាក្រៅពីទ្រង់ឡើយ។ ចំណែកឯកុសលបុគ្គលមិនអាចធ្វើអ្វីបានឡើយ។ តែគោលបំណងរបស់ខ្ញុំចំពោះពួកគេចង់ឱ្យពួកគេជួយសង្គ្រោះចំពោះ អល់ឡោះ តែប៉ុណ្ណោះ។

អាប់ឌល់ឡោះ៖ សម្តីរបស់អ្នកនិងសម្តីរបស់ពួកកាហ្វៀរដូចគ្នា។ ភស្តុតាងបញ្ជាក់ដោយព្រះបន្ទូលរបស់ទ្រង់ថា៖

﴿وَيَعْبُدُونَ مِن دُونِ ٱللَّهِ مَا لَا يَضُرُّهُمْ وَلَا يَنفَعُهُمْ وَيَقُولُونَ هَٰٓؤُلَآءِ شُفَعَٰٓؤُنَا عِندَ ٱللَّهِ﴾ មានន័យថា "ពួកគេគោរពសក្ការៈផ្សេងពី អល់ឡោះ ដែលវាមិនអាចបង្កគ្រោះថ្នាក់ ឬផ្តល់ប្រយោជន៍ដល់ពួកគេ ហើយពួកគេនិយាយថាពួកគេទាំងនេះជាអ្នកជួយអន្តរាគមន៍ដល់ពួកយើងនៅចំពោះ អល់ឡោះ។ (យ៉ូណុះ : ១៨)

អាប់ឌន់ណាពី៖ តែខ្ញុំមិនគោរពសក្ការៈទេលើកលែងតែ អល់ឡោះ ហើយការពឹងពាក់ចំពោះពួកគេ និងការបួងសួងចំពោះពួកគេមិនមែនជាការគោរពសក្ការៈទេ!

អាប់ឌល់ឡោះ៖ តែខ្ញុំសុំសួរអ្នកថាតើអ្នកឯកភាពថា អល់ឡោះ ដាក់កាតព្វកិច្ចឱ្យអ្នកគោរពសក្ការៈចំពោះទ្រង់ដោយចិត្តស្មោះសទេ?

ហើយជាតួនាទីដែលអ្នកត្រូវបំពេញដូច អល់ឡោះ បានមានព្រះបន្ទូលថា៖

﴿وَمَآ أُمِرُوٓا۟ إِلَّا لِيَعْبُدُوا۟ ٱللَّهَ مُخْلِصِينَ لَهُ ٱلدِّينَ حُنَفَآءَ﴾ មានន័យថា "គេមិនបង្គាប់ឱ្យពួកគេធ្វើអ្វីក្រៅពីការគោរពសក្ការៈចំពោះ អល់ឡោះ ដោយចិត្តស្មោះសនិងត្រឹមត្រូវនោះឡើយ។ (អាល់ហ្ពៃយីណះ : ៥)

អាប់ឌន់ណាពី៖ បាទ! ទ្រង់បានដាក់កាតព្វកិច្ចចំពោះខ្ញុំឱ្យធ្វើបែបនោះមែន។

អាប់ឌល់ឡោះ៖ ខ្ញុំចង់ឱ្យអ្នកបកស្រាយប្រាប់ខ្ញុំពីកាតព្វកិច្ចដែល អល់ឡោះ




បានដាក់ចំពោះអ្នក គឺការគោរពសក្ការៈដោយចិត្តស្មោះស។
អាប់ឌុន់ណាពី៖ ខ្ញុំមិនយល់ តើអ្នកចង់សំដៅដល់អ្វីទាក់ទងនឹងសំណួរនេះ សូមបញ្ជាក់ប្រាប់ខ្ញុំផង។
អាប់ឌុល់ឡោះ៖ សូមស្តាប់ខ្ញុំ ខ្ញុំនឹងពន្យល់ឱ្យបានច្បាស់។ អល់ឡោះ បានមានព្រះបន្ទូលថា៖﴿ ٱدۡعُواْ رَبَّكُمۡ تَضَرُّعٗا وَخُفۡيَةًۚ إِنَّهُۥ لَا يُحِبُّ ٱلۡمُعۡتَدِينَ ﴾ មានន័យថា "**ចូរពួកអ្នកបួងសួងសុំពីម្ចាស់របស់ពួកអ្នកដោយឱនលំទោននិងទន់ភ្លន់ ពិតប្រាកដណាស់ទ្រង់មិនស្រលាញ់ពួកដែលបំពានឡើយ។**(អាល់អាក់រ៉ហ្វ : ៥៥)
តើទូអាជាការគោរពសក្ការៈចំពោះ អល់ឡោះ ដែរឬទេ?
អាប់ឌុន់ណាពី៖ បាទ! វាជាប្រភេទនៃអ៊ីបើហ្ទាត ដែលមានបញ្ជាក់នៅក្នុងហាទីសថា៖ មានន័យថា (**ការបួងសួងជាការគោរពសក្ការៈ**) (អាត្ទីរ៉្មីស)
អាប់ឌុល់ឡោះ៖ បើខ្ញុំនៅតែទទួលស្គាល់ការគោរពសក្ការៈចំពោះ អល់ឡោះ ហើយខ្ញុំបួងសួងចំពោះទ្រង់ទាំងថ្ងៃទាំងយប់ដោយការកោតខ្លាច និងប្រាថ្នាចង់បានអ្វីមួយ។ បន្ទាប់មក ខ្ញុំយកតម្រូវការនោះទៅសុំពីណាពី ទេវតា និងកុសលបុគ្គលនៅក្នុងផ្នូររបស់គេ។

**តើខ្ញុំធ្វើស្ហ៊ីរិកក្នុងការគោរពសក្ការៈដែរមែនទេ?**

អាប់ឌុន់ណាពី៖ បាទ! អ្នកពិតជាស្ហ៊ីរិកហើយ នេះជាពាក្យសម្តីដែលត្រឹមត្រូវច្បាស់លាស់។
អាប់ឌុល់ឡោះ៖ ឧទាហរណ៍មួយទៀត បើអ្នកដឹងពីព្រះបន្ទូលរបស់ អល់ឡោះ ថា៖ ﴿ فَصَلِّ لِرَبِّكَ وَٱنۡحَرۡ ﴾មានន័យថា "**ចូរសឡាតនិងសម្លេះសត្វដើម្បីម្ចាស់របស់អ្នក។** (អាល់កៅស៊ើរ : ២)

**អ្នកធ្វើតាមបញ្ជា អល់ឡោះ ហើយសម្លេះដើម្បីទ្រង់។ តើការសម្លេះរបស់អ្នកជាការគោរពសក្ការៈចំពោះទ្រង់ដែរឬទេ?**

អាប់ឌុន់ណាពី៖ បាទ! វាជាការគោរពសក្ការៈ។
អាប់ឌុល់ឡោះ៖ បើខ្ញុំសម្លេះដើម្បីណាពី ឬជិន ឬផ្សេងពីអ្នកទាំងពីររួមជាមួយអល់ឡោះ។ តើការគោរពសក្ការៈរបស់ខ្ញុំផ្សេងពី អល់ឡោះ ស្ហ៊ីរិកឬក៏អត់?
អាប់ឌុន់ណាពី៖ បាទ! នេះជាអំពើស្ហ៊ីរិកដោយគ្មានការសង្ស័យឡើយ។
អាប់ឌុល់ឡោះ៖ ខ្ញុំលើកឧទាហរណ៍ជូនអ្នកអំពីទូអានិងសម្លេះ ពីព្រោះទូអាជាការគោរពសក្ការៈខាងវាចា ហើយសម្លេះជាការគោរពសក្ការៈខាងកាយ ហើយការគោរពសក្ការៈនេះមិនមែនមានត្រឹមតែកាយនិងវាចាប៉ុណ្ណោះទេ។ នៅមានច្រើនជាងនោះទៅទៀតដូចជាការប្រាថ្នា ស្បថ សុំបញ្ចៀស និងសុំជំនួយ។ល។ តែពួកមុសរីគីនដែល អល់ឡោះ បានបញ្ចុះគួរអានស្តីអំពីពួកគេ។ តើពួកគេគោរពពួកទេវតា កុសលបុគ្គល




រូបជិមា... ដែរឬទេ ?
អាប់ឌុន់ណាពី៖ បាទ! ពួកគេពិតជាធ្វើបែបនោះមែន។
អាប់ឌុល់ឡោះ៖ ការគោរពសក្ការៈរបស់ពួកគេមានតែទូអា ការសម្លេះ ការសុំបញ្ចៀស ការសុំជំនួយ និងការពឹងពាក់។ ប៉ុន្តែពួកគេទទួលស្គាល់ថាខ្លួនជាខ្ញុំរបស់ អល់ឡោះ ហើយឋិតក្រោមអំណាចរបស់ទ្រង់។ ហើយ អល់ឡោះ ទ្រង់ជាអ្នកចាត់ចែង ។ ក៏ប៉ុន្តែ ពួកគេទូអានិងពឹងពាក់ដល់អ្នកទាំងនោះព្រោះដោយសារឋានៈនិងការអន្តរាគមប៉ុណ្ណោះ។ នេះជាការពិត។
អាប់ឌុន់ណាពី៖ នែ! អាប់ឌុល់ឡោះ តើអ្នកប្រកែកនិងបដិសេធចំពោះការអន្តរាគមរបស់ណាពីដែរឬទេ ?
អាប់ឌុល់ឡោះ៖ ទេ! ខ្ញុំមិនប្រកែកទេ។ ខ្ញុំហ៊ានលះបង់ឪពុកម្តាយខ្ញុំដើម្បីគាត់។ ណាពីជាអ្នកជួយអន្តរាគមន៍ សង្ឃឹមថាខ្ញុំនឹងទទួលបានការអន្តរាគមពីគាត់ តែការអន្តរាគមទាំងអស់ស្ថិតនៅលើ អល់ឡោះ តែមួយគត់។ អល់ឡោះ បានមានព្រះបន្ទូលថា៖ ﴿قُل لِّلَّهِ ٱلشَّفَٰعَةُ جَمِيعًا﴾ មានន័យថា "**ការអន្តរាគមទាំងអស់គឺជាកម្មសិទ្ធិរបស់ អល់ឡោះ។**(អាសហ្សូមើរ : ៤៤)
មិនអាចអន្តរាគមបានឡើយលើកលែងតែមានការអនុញ្ញាតពី អល់ឡោះ។ អល់ឡោះ បានមានព្រះបន្ទូលថា៖﴿مَن ذَا ٱلَّذِى يَشْفَعُ عِندَهُۥٓ إِلَّا بِإِذْنِهِۦ﴾ មានន័យថា "**គ្មានបុគ្គលណាហ៊ានធ្វើអន្តរាគមន៍ចំពោះ អល់ឡោះ លើកលែងតែមានការអនុញ្ញាតពីទ្រង់។** (អាល់ហ្គោករ៉ោះ : ២៥៥)
គ្មាននរណាម្នាក់អាចអន្តរាគមបានឡើយលើកលែងតែមានការអនុញ្ញាតពី អល់ឡោះ។ អល់ឡោះ បានមានព្រះបន្ទូលថា៖ ﴿وَلَا يَشْفَعُونَ إِلَّا لِمَنِ ٱرْتَضَىٰ﴾ មានន័យថា "**ពួកទេវតាមិនអាចធ្វើអន្តរាគមន៍ដល់អ្នកណាក្រៅពីអ្នកដែលទ្រង់បានយល់ព្រម។** (អាល់អាំពីយ៉ាក : ២៨)
**ទ្រង់មិនអនុញ្ញាតឡើយលើកលែងចំពោះអ្នកដែលមានជំនឿ។ អល់ឡោះ** បានមានព្រះបន្ទូលថា៖ ﴿وَمَن يَبْتَغِ غَيْرَ ٱلْإِسْلَٰمِ دِينًا فَلَن يُقْبَلَ مِنْهُ وَهُوَ فِى ٱلْءَاخِرَةِ مِنَ ٱلْخَٰسِرِينَ﴾
មានន័យថា "**អ្នកណាដែលស្វែងរកសាសនាក្រៅពីឥស្លាម អល់ឡោះ នឹងមិនទទួលយក(អំពើល្អ)របស់គេឡើយ។ នៅថ្ងៃបរលោក គេឋិតក្នុងចំណោមអ្នកដែលខាតបង់។**(អាលីអ៊ីមរ៉ន : ៨៥)
ការអន្តរាគមទាំងអស់ជាកម្មសិទ្ធិរបស់ អល់ឡោះ។ មិនអាចអន្តរាគមបានឡើយលើកលែងតែមានការអនុញ្ញាតពីទ្រង់។ ណាពីនិងអ្នកដទៃទៀតមិនអាចអន្តរាគមបានឡើយលើកលែងតែមានការអនុញ្ញាតពីទ្រង់។ អល់ឡោះ មិនអនុញ្ញាតឱ្យទេលើកលែងតែចំពោះអ្នកដែលមានជំនឿ។ អីចឹង! ការអន្តរាគមទាំងអស់គឺជាកម្ម





សិទ្ធិរបស់ អល់ឡោះ។ ដូច្នេះ ខ្ញុំសុំវាពីទ្រង់។ បពិត្រ អល់ឡោះ ជាម្ចាស់សូមទ្រង់កុំរាំងខ្ញុំពីការជួយអន្តរាគមរបស់គាត់។ ឱ! អល់ឡោះ ជាម្ចាស់សូមទ្រង់អនុញ្ញាតឱ្យអ្នកនាំសាររបស់ទ្រង់ជួយអន្តរាគមដល់ខ្ញុំផង។ល។

អាប់ឌន់ណាពី៖ យើងបានឯកភាពគ្នាថាមិនអនុញ្ញាតឱ្យសុំពីនរណាម្នាក់ដែលគ្មានសិទ្ធិឡើយ។ អល់ឡោះ អនុញ្ញាតឱ្យណាពីធ្វើអន្តរាគមន៍បាន ពីព្រោះគាត់ទទួលបានការអន្តរាគម ហើយគាត់មានសិទ្ធិ។ ហេតុនេះ គេអនុញ្ញាតឱ្យសុំពីអ្នកដែលមានលទ្ធភាព ហើយពុំមែនជាការស្ទីរិកនោះទេ។

អាប់ឌល់ឡោះ៖ បាទ! សម្ដីនេះត្រឹមត្រូវហើយ។ បើសិនជា អល់ឡោះ មិនបានរាំងអ្នកពីរឿងនោះទេ។ ដោយ អល់ឡោះ បានមានព្រះបន្ទូលថា៖ ﴿فَلَا تَدْعُوا مَعَ ٱللَّهِ أَحَدًا﴾ មានន័យថា "**ចូរពួកអ្នកកុំបួងសួងសុំនរណាម្នាក់រួមជាមួយ អល់ឡោះ។**(អាល់ជីន : ១៨)

ការសុំអន្តរាគមន៍គឺជាទូអា ហើយអ្នកដែលអនុញ្ញាតឱ្យណាពីធ្វើអន្តរាគមន៍គឺ អល់ឡោះ។ ទ្រង់ជាអ្នកហាមឃាត់អ្នកមិនឱ្យសុំពីអ្នកដទៃ ទោះបីជាសុំអ្វីក៏ដោយ។ ពិតណាស់ ការអន្តរាគម អល់ឡោះ បានប្រទានឱ្យអ្នកដទៃក្រៅពីណាពី។ ដូច្នេះ ទេវតាក៏អាចអន្តរាគមបានដែរ។ អ័ហ្វរ៉ត គឺជាក្មេងដែលស្លាប់មុនគ្រប់អាយុ ក៏អាចអន្តរាគមបានដែរ ព្រមជាមួយវ៉ាលីផងដែរ។ តើអ្នកអាចនិយាយថាបើ អល់ឡោះ ប្រទានឱ្យពួកគេ។ តើខ្ញុំអាចសុំពីពួកគេបានដែរឬទេ? បើអ្នកនិយាយបែបនេះ អ្នកច្បាស់ជានឹងត្រឡប់ទៅគោរពកុសលបុគ្គលដែល អល់ឡោះ បានមានព្រះបន្ទូលក្នុងគម្ពីររបស់ទ្រង់។ បើអ្នកនិយាយថា អត់ទេ នោះសម្ដីរបស់អ្នកចាត់ទុកជាមោឃៈ។ អល់ឡោះ បានប្រទានការអន្តរាគមដល់គេ ដូច្នេះខ្ញុំសុំពីគេតាមអ្វីដែល អល់ឡោះ បានប្រទានឱ្យ។

អាប់ឌន់ណាពី៖ តែខ្ញុំមិនធ្វើស្ទីរិកចំពោះទ្រង់ទេ ហើយការពឹងពាក់ចំពោះកុសលបុគ្គលមិនមែនស្ទីរិកទេ។

អាប់ឌល់ឡោះ៖ តើអ្នកទទួលស្គាល់និងឯកភាពថា អល់ឡោះ ហាមប្រការស្ទីរិកខ្លាំងជាងហាមប្រការហ្ស៊ីណា ហើយ អល់ឡោះ មិនអនុគ្រោះឱ្យគេដែរឬទេ?

អាប់ឌន់ណាពី៖ បាទ! ខ្ញុំឯកភាព! មានចែងច្បាស់ពីបញ្ហានេះនៅក្នុងព្រះបន្ទូលរបស់ទ្រង់។

អាប់ឌល់ឡោះ៖ អ្នកបានបដិសេធប្រការស្ទីរិកដែល អល់ឡោះ បានហាមឃាត់ចេញពីខ្លួនរបស់អ្នក។ តើអ្នកអាចបកស្រាយប្រាប់ខ្ញុំបានដែរឬទេ អ្វីទៅជាការធ្វើស្ទីរិកចំពោះ អល់ឡោះ ដែលអ្នកមិនធ្លាប់បានធ្វើ ហើយបានបដិសេធវា?

អាប់ឌន់ណាពី៖ ស្ទីរិកគឺការគោរពសក្ការៈចំពោះរូបចម្លាក់ ឧទ្ទិសចំពោះវា សុំពីវា និងខ្លាចវា។



អាប់ឧល់ឡោះ៖ តើការគោរពរូបចម្លាក់មានន័យដូចម្ដេច? តើអ្នកគិតថា ពួកកូរេស្ស មានជំនឿថាដើមឈើ ដុំថ្មអាចបង្កើត អាចប្រទានលាភសក្ការៈ និងចាត់ចែងជូនអ្នកដែលបានបួងសួងសុំវាដែរឬទេ? ពួកគេមិនជឿដូចអ្វីដែលអ្នកនិយាយនោះទេ។

អាប់ឧន់ណាពី៖ ខ្ញុំក៏មិនជឿអ៊ីចឹងដែរ។ តែអ្នកដែលសំដៅទៅរក រូបចម្លាក់ឈើ រូបបដិមា ឬសង់អ្វីនៅលើផ្នូរ ឬអ្វីផ្សេងទៀត។ ទៅបួងសួងសុំពីវត្ថុទាំងនោះ ហើយសម្លេះសត្វបូជាវា។ ពួកគេនិយាយថា វត្ថុទាំងនោះជួយឱ្យយើងបញ្ជិតខ្លួនចំពោះ អល់ឡោះ កាន់តែជិត។ អល់ឡោះ ការពារយើងដោយពរជ័យរបស់ទ្រង់។ នេះជាការគោរពសក្ការៈរូបចម្លាក់ដែលខ្ញុំចង់និយាយ។

អាប់ឧល់ឡោះ៖ ពិតហើយ! តែនេះជាអ្វីដែលពួកអ្នកបានធ្វើចំពោះដុំថ្ម រូបសំណាក ចេតិយ។ល។ អ្នកនិយាយទៀតថា ស្ហ៊ីរិកគឺការគោរពសក្ការៈចំពោះរូបចម្លាក់។ តើអ្នកចង់មានន័យថា ស្ហ៊ីរិកចំពោះតែការគោរពរូបចម្លាក់តែប៉ុណ្ណោះមែនទេ? ការពឹងពាក់ចំពោះកុសលបុគ្គល និងបួងសួងសុំពួកគេមិនចាត់ទុកថាជាប្រការស្ហ៊ីរិកទេឬ?

អាប់ឧន់ណាពី៖ បាទ! នេះជាអ្វីដែលខ្ញុំចង់និយាយ។

អាប់ឧល់ឡោះ៖ បើអ៊ីចឹង ចុះឯណាព្រះបន្ទូល អល់ឡោះ ដែលហាមមិនឱ្យពឹងពាក់ពួកណាពី កុសលបុគ្គល ពួកទេវតា និងអ្នកដទៃទៀត។ ជនណាធ្វើបែបនេះគឺកាហ្វៀរ។ ដូចដែលខ្ញុំបាននិយាយប្រាប់អ្នក និងបង្ហាញភស្តុតាងបញ្ជាក់ប្រាប់អ្នកពីខាងដើម។

អាប់ឧន់ណាពី៖ ក៏ប៉ុន្តែពួកអ្នកដែលសុំទេវតានិងពួកណាពី មិនក្លាយជាកាហ្វៀរដោយសារមូលហេតុនេះទេ។ តែពួកគេក្លាយជាកាហ្វៀរនៅពេលពួកគេថាពិតណាស់ទេវតាជាកូនស្រីរបស់ អល់ឡោះ អ៊ីសារជាកូនប្រុសរបស់ អល់ឡោះ។ យើងមិនបាននិយាយថា អាប់ឧល់កាហ្វៀរជាកូន អល់ឡោះ និងហ្សៃណាប់ជាកូនស្រីរបស់ អល់ឡោះ នោះទេ។

អាប់ឧល់ឡោះ៖ ការនិយាយថា អល់ឡោះ មានកូនគឺជារឿងកាហ្វៀរមួយដោយគ្មានការសង្ស័យឡើយ។ អល់ឡោះ បានមានព្រះបន្ទូលថា៖ ﴿قُلْ هُوَ اللَّهُ أَحَدٌ ۝١ اللَّهُ الصَّمَدُ ۝٢ لَمْ يَلِدْ وَلَمْ يُولَدْ﴾ មានន័យថា "**ចូរពោលថា (មូហាំម៉ាត់) អល់ឡោះ ជាម្ចាស់តែមួយ អល់ឡោះជាម្ចាស់ដែលគេត្រូវពឹងពាក់ ទ្រង់គ្មានកូន ហើយគ្មានគេបង្កើតទ្រង់។**(អាល់អ៊ិខ្លាស:១-៣)

ពាក្យថា «الأحد» គ្មានអ្វីប្រៀបប្រដូចនឹងទ្រង់ឡើយ។ ពាក្យ «الصمد» អ្នកដែលគេត្រូវពឹងពាក់។ ជនណាប្រឆាំងគឺជាកាហ្វៀរ ទោះបីជាគេមិនបានបដិសេធនៅចុងសូរ៉ោះនេះក៏ដោយ។ អល់ឡោះ បានមានព្រះបន្ទូលថា៖

﴿مَا اتَّخَذَ اللَّهُ مِن وَلَدٍ وَمَا كَانَ مَعَهُ مِنْ إِلَٰهٍ ۚ إِذًا لَّذَهَبَ كُلُّ إِلَٰهٍ بِمَا خَلَقَ وَلَعَلَا بَعْضُهُمْ عَلَىٰ بَعْضٍ﴾ មាន




ន័យថា "**អល់ឡោះ ពុំមានបុត្រឡើយ ហើយក៏ពុំមានម្ចាស់ណាដែលគេគោរពសក្ការៈដ៏ពិតប្រាកដរួមជាមួយនឹងទ្រង់ដែរ។ ប្រសិនបើមានមែន ម្ចាស់នីមួយៗច្បាស់ជាយកអ្វីដែលខ្លួនបានបង្កើត ហើយពួកគេនឹងយកប្រៀបលើគ្នា។** (អាល់មុមីនូន : ៩១) ទ្រង់បានញែករវាងកាហ្វៀរទាំងពីរប្រភេទ។ ភស្តុតាងនេះបញ្ជាក់ថា ពួកអ្នកដែលក្លាយកាហ្វៀរក៏ដោយសារពួកគេសុំបួងសួងពី អាល់ឡាត ថ្វីតថា អាល់ឡាត នេះជាកុសលបុគ្គល ហើយពួកគេពុំបានចាត់ទុកគាត់ជាកូនរបស់ អល់ឡោះ នោះទេ។ ពួកអ្នកដែលក្លាយជាកាហ្វៀរដោយការគោរពសក្ការៈចំពោះជិន ក៏ពុំបានយកជិនធ្វើដូច្នោះដែរ។ ក៏ដូចគ្នាដែរ និកាយទាំងបួនបាននិយាយក្នុងអត្ថបទ(ច្បាប់អ្នកចេញពីឥស្លាម)ថាបើអ្នកម៉ូស្លីមគិតថា អល់ឡោះ មានកូននោះគឺគេចេញពីសាសនាឥស្លាម ហើយបើគេធ្វើស្ទីរិកជាមួយ អល់ឡោះ នោះគេគឺជាអ្នកដែលចេញពីសាសនាឥស្លាមដែរ។ ដូច្នេះ ផ្នែកទាំងពីរនេះខុសគ្នា។

អាប់ឌុន់ណាពី៖ តែ អល់ឡោះ បានមានព្រះបន្ទូលថា៖

﴿أَلَآ إِنَّ أَوْلِيَآءَ ٱللَّهِ لَا خَوْفٌ عَلَيْهِمْ وَلَا هُمْ يَحْزَنُونَ﴾ មានន័យថា

"**តើមិនមែនទេឬ ពួកវ៉ាលី(ពួកអ្នកមានជំនឿដ៏ស្មោះត្រង់ចំពោះ អល់ឡោះ) ពិតជាគ្មានការភ័យខ្លាចចំពោះពួកគេ ហើយពួកគេក៏គ្មានទុក្ខព្រួយអ្វីដែរ។** (យ៉ូណុះ:៦២)

អាប់ឌុល់ឡោះ៖ យើងជឿថាវាពិតជាត្រឹមត្រូវ ហើយយើងក៏ថាអ៊ីចឹងដែរ តែពួកគេពុំត្រូវបានគេគោរពសក្ការៈនោះទេ។ យើងក៏មិនប្រកែកដែរ លើកលែងតែការគោរពសក្ការៈពួកគេរួមជាមួយ អល់ឡោះ និងយកពួកគេជាដៃគូរបស់ទ្រង់ប៉ុណ្ណោះ។ ក្រៅពីនោះ គឺចាំបាច់ត្រូវស្រឡាញ់ពួកគាត់ ពួកអ្នកដែលតាមពួកគាត់ និងទទួលស្គាល់ពីបារមីរបស់ពួកគាត់។ មិនត្រូវបដិសេធពីបារមីរបស់ពួកវ៉ាលីទេ លើកលែងតែពួកធ្វើពិដអះ។ សាសនារបស់ អល់ឡោះ ឋិតនៅចំកណ្តាលនៃភាគីទាំងពីរ និងជាសេចក្តីចង្អុលបង្ហាញឋិតនៅចន្លោះក្តីវង្វេងទាំងពីរ ហើយជាសច្ចភាពឋិតនៅចន្លោះរវាងអសច្ចភាពទាំងពីរ។

អាប់ឌុន់ណាពី៖ ពួកអ្នកដែលគម្ពីរអាល់គួរអាន បាននិយាយអំពីរឿងរ៉ាវរបស់ពួកគេ គឺពួកគេមិនធ្វើសាក្សីថា (لا إله إلا الله) គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដ លើកលែងតែ អល់ឡោះ។ ពួកគេមិនជឿចំពោះពួកអ្នកនាំសារ មិនជឿចំពោះការរស់ឡើងវិញ។ ពួកគេមិនជឿចំពោះគម្ពីរអាល់គួរអាន ហើយពួកគេចាត់ទុកគម្ពីរអាល់គួរអានជាមន្តអាគមថែមទៀត។ ចំណែកឯពួកយើងធ្វើសាក្សីថាពិតណាស់ម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែ អល់ឡោះ ហើយ មូហាំម៉ាត់ ជាអ្នកនាំសាររបស់ អល់ឡោះ។ យើងជឿចំពោះគម្ពីរអាល់គួរអាន ជឿចំពោះថ្ងៃរស់ឡើងវិញ យើងសឡាត យើងបួស ហេតុអ្វីបានជាអ្នកចាត់ទុកយើងដូចពួកគេ?



អាប់ឧល់ឡោះ៖ តែពួកសាសនវិទូទាំងអស់មិនបានខ្វែងយោបល់គ្នាទេថា បុគ្គលម្នាក់ក្លាយជាកាហ្វៀរ បើគេជឿចំពោះអ្នកនាំសារខ្លះ និងបដិសេធចំពោះអ្នកនាំសារផ្សេងទៀត។ ដូចគ្នាដែរការជឿចំពោះគម្ពីរអាល់គួរអានខ្លះ ហើយបដិសេធអ្វីផ្សេងទៀតនៃគម្ពីរ។ ដូចជាអ្នកដែលមានជំនឿ ហើយបដិសេធចំពោះសឡាត ឬមានជំនឿ និងសឡាត តែបដិសេធចំពោះហ្សាកាត់ ឬទទួលស្គាល់ទាំងអស់តែបដិសេធចំពោះការបួស ឬទទួលស្គាល់ទាំងអស់តែបដិសេធចំពោះបុណ្យហាជ្ជ។

នៅសម័យណាពីមនុស្សមិនដែលបដិសេធចំពោះបុណ្យហាជ្ជទេ។ អល់ឡោះបានបញ្ចុះព្រះបន្ទូលស្តីអំពីពួកគេថា៖

﴿وَلِلَّهِ عَلَى ٱلنَّاسِ حِجُّ ٱلْبَيْتِ مَنِ ٱسْتَطَاعَ إِلَيْهِ سَبِيلًا ۚ وَمَن كَفَرَ فَإِنَّ ٱللَّهَ غَنِىٌّ عَنِ ٱلْعَٰلَمِينَ﴾ មានន័យថា "**អល់ឡោះ បានដាក់កាតព្វកិច្ចលើមនុស្សលោកឱ្យធ្វើបុណ្យហាជ្ជនៅវិហាររបស់ អល់ឡោះ ចំពោះអ្នកដែលមានលទ្ធភាពទៅដល់។ បើនរណាបដិសេធពិតណាស់ អល់ឡោះ មិនត្រូវការអ្វីមួយពីពិភពលោកឡើយ។** (អាលីអ៊ីមរ៉ន : ៩៧)

បើបដិសេធចំពោះការរស់ឡើងវិញ ពួកសាសនវិទូបានឯកភាពគ្នាថាកាហ្វៀរ។ អល់ឡោះ បានបញ្ជាក់ច្បាស់ក្នុងគម្ពីររបស់ទ្រង់ថាជនណាមានជំនឿខ្លះ ហើយមិនជឿខ្លះ ជននោះគឺជាកាហ្វៀរយ៉ាងពិតប្រាកដ។ ទ្រង់បានបង្គាប់ឱ្យទទួលយកឥស្លាមទាំងស្រុង។ ជនណាទទួលយកខ្លះនិងបដិសេធខ្លះ ពិតណាស់ជននោះគឺជាកាហ្វៀរ។ តើអ្នកទទួលស្គាល់ថាអ្នកដែលមានជំនឿខ្លះនិងបដិសេធខ្លះជាកាហ្វៀរដែរឬទេ?

អាប់ឧន់ណាពី៖ បាទ! ខ្ញុំឯកភាពលើរឿងនេះ

ហើយវាមានបញ្ជាក់យ៉ាងច្បាស់ក្នុងគម្ពីរអាល់គួរអាន។

អាប់ឧល់ឡោះ៖ បើអ្នកទទួលស្គាល់ថាអ្នកដែលមានជំនឿចំពោះអ្នកនាំសាររបស់ អល់ឡោះ លើអ្វីមួយហើយបដិសេធចំពោះកាតព្វកិច្ចសឡាត ឬទទួលស្គាល់ទាំងអស់តែបដិសេធចំពោះការរស់ឡើងវិញ គេគឺជាកាហ្វៀរដោយការឯកភាពពីនិកាយទាំងបួន។ អាល់គួរអានបានបញ្ជាក់រួចហើយ។ ចូរជ្រាបចុះថាតាវហេតជាកាតព្វកិច្ចមួយយ៉ាងសំខាន់ដែលណាពីបាននាំមកគឺសំខាន់ជាងសឡាត ហ្សាកាត់ និងបុណ្យហាជ្ជ។ បើសិនជាបុគ្គលណាបដិសេធចំពោះប្រការអ្វីមួយនៃប្រការទាំងនេះ បុគ្គលនោះក្លាយជាកាហ្វៀរ ទោះបីជាគេអនុវត្តទាំងអស់នូវអ្វីដែលអ្នកនាំសារបាននាំមក។ យ៉ាងណាមិញ បើគេបដិសេធតាវហេតដែលជាសាសនារបស់ពួកអ្នកនាំសារ រឿងអីមិនមែនជាកាហ្វៀរនោះ! មហាជ្រះស្អាត អល់ឡោះ! ហេតុអ្វីក៏ល្ងង់ខ្លៅបែបនេះ!

ចូរពិចារណាចំពោះសាវ័ក(សហាហ្បាត់) ណាពីដែលធ្វើសង្គ្រាមជាមួយកុលសម្ព័ន្ធហានីហ្វះនៅយ៉ាម៉ាម៉ះ។ ពួកនេះបានចូលឥស្លាមជាមួយណាពី ហើយពួកគេ




អះអាងថាគ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែ អល់ឡោះ ហើយ មូហាំម៉ាត់ ជាអ្នកនាំសាររបស់ អល់ឡោះ។ ពួកគេសឡាត និងអាហ្សាន។
អាប់ឌុន់ណាពី៖ តែពួកគេអះអាងថា មូសៃឡាម៉ះ ជាណាពីហើយយើងថាគ្មានណាពីណាមកបន្ទាប់ពីណាពីមូហាំម៉ាត់។
អាប់ឌុល់ឡោះ៖ តែពួកគេលើកតម្កើងអាលី ឬអាប់ឌុល់កទៀរ ឬអ្នកដទៃទៀតក្រៅពីអ្នកទាំងពីរ ក្រៅពីពួកណាពី ឬទេវតា ដល់ថ្នាក់ស្មើនឹងម្ចាស់មេឃនិងផែនដី។ បើជនណាលើកបុគ្គលណាម្នាក់ស្មើនឹងណាពី ជននោះគឺជាកាហ្វៀរ។ ទ្រព្យសម្បត្តិនិងជីវិតរបស់គេក្លាយជាហាឡាល់។ ពាក្យសាក្សីទាំងពីររបស់គេនិងសឡាតរបស់គេគ្មានប្រយោជន៍អ្វីសម្រាប់រូបគេនោះទេ។ បើជនណាត្រូវគេលើកតម្កើងស្មើនឹងឋានៈ អល់ឡោះ គឺវារឹតតែក្លាយជាកាហ្វៀរខ្លាំងជាងនោះទៅទៀត។ ដូចគ្នាផងដែរ អ្នកដែលអាលីបានដុតពួកគេ គឺពួកគេទាំងនោះទទួលស្គាល់ឥស្លាម ហើយពួកគេជាសាវ័កអាលី។ ពួកគេរៀននិងទទួលចំណេះដឹងពីសហការីរបស់ណាពី។ តែពួកគេជឿចំពោះ អាលី ដូចជាពួកគេជឿចំពោះ អាប់ឌុល់កទៀរនិងអ្នកដទៃទៀត។ ចុះហេតុម្តេចបានជាគេអំពាវនាវសហការីណាពី ដើម្បីប្រយុទ្ធប្រឆាំងនឹងពួកគេ ហើយចាត់ទុកពួកគេជាកាហ្វៀរទៅវិញ? តើអ្នកគិតថាសហការីណាពីចោទអ្នកឥស្លាមថាជាកាហ្វៀរឬ? ឬក៏អ្នកគិតថា មានជំនឿចំពោះវ៉ាលី(សន្តតិបុគ្គល) អ្នកដទៃទៀតគ្មានផលប៉ះពាល់ ហើយមានជំនឿចំពោះអាលីចាត់ទុកថាជាកាហ្វៀរឬ?
គេនិយាយផងដែរថា បើអ្នកជំនាន់មុនមិនបានចាត់ទុកនរណាម្នាក់ជាកាហ្វៀរទេ លុះត្រាតែពួកគេផ្តុំគ្នារវាងប្រការស្ទើរិក ការបដិសេធចំពោះអ្នកនាំសារនិងគម្ពីរអាល់គួរអាន មិនជឿចំពោះថ្ងៃរស់ឡើងវិញនិងប្រការផ្សេងទៀត។ ចុះមានន័យយ៉ាងម៉េចទៅវិញចំពោះជំពូក១ ដែលពួកសាសនវិទូបានលើកឡើងក្នុងគ្រប់និកាយទាំងអស់ស្តីអំពី(ជំពូកស្តីអំពីច្បាប់អ្នកចេញពីឥស្លាម) អ្នកឥស្លាមដែលប្រឆាំងបន្ទាប់ពីចូលឥស្លាម។ បន្ទាប់មក ពួកគេបានបកស្រាយច្រើនប្រភេទ។ គ្រប់ប្រភេទនីមួយៗសុទ្ធតែធ្វើឱ្យអ្នកប្រព្រឹត្តចេញពីឥស្លាម។ រហូតដល់ពួកគេបានលើកឡើងពីប្រការសាមញ្ញៗដែលគេប្រព្រឹត្តវាដូចជាពាក្យដែលធ្វើឱ្យ អល់ឡោះ ក្រោធខឹង។ គេគន្លាស់អណ្តាតចេញមកដោយគ្មានចេតនាឬការតាំងចិត្ត។ ជីវិតនិងទ្រព្យសម្បត្តិបុគ្គលនោះត្រូវគេអនុញ្ញាតសម្លាប់ ឬនិយាយក្នុងន័យលេងសើច កំប្លែងលេង។ ដូចគ្នាពួកអ្នកដែល អល់ឡោះ បានមានព្រះបន្ទូលអំពីពួកគេថា៖ ﴿قُلْ أَبِٱللَّهِ وَءَايَـٰتِهِۦ وَرَسُولِهِۦ كُنتُمْ تَسْتَهْزِءُونَ ۝٦٥ لَا تَعْتَذِرُوا۟ قَدْ كَفَرْتُم بَعْدَ إِيمَـٰنِكُمْ﴾ មានន័យថា **"ចូរពោលថាតើពួកអ្នកប្រមាថមើលងាយចំពោះ អល់ឡោះ និមិត្តសញ្ញា**




**របស់ទ្រង់និងអ្នកនាំសាររបស់ទ្រង់ឬ? អ្នកមិនចាំបាច់ដោះសារទៀតទេ។ ជាការពិតណាស់ ពួកអ្នកបានប្រឆាំងក្រោយពីពួកអ្នកមានជំនឿ។**(អាត់តៅហ្ពះ : ៦៥)
ពួកគេជាអ្នកដែល អល់ឡោះ បានប្រកាសថាពួកគេជាពួកដែលប្រឆាំងបន្ទាប់ពីពួកគេមានជំនឿ ខណៈពេលដែលពួកគេបានចូលរួមជាមួយអ្នកនាំសារនៅសមរភូមិតាពូក។ ពួកគេបានពោលពាក្យសាក្សីដោយលេងសើច។

**គេបាននិយាយផងដែរថា** អល់ឡោះ បាននិយាយពីរឿងអម្បូរអ៊ីស្រាអែលជាមួយនឹងគោលជំនឿ ចំណេះដឹង និងភាពត្រឹមត្រូវរបស់ពួកគេថា ពួកគេបាននិយាយទៅកាន់មូសាថា ﴿ ٱجۡعَل لَّنَآ إِلَٰهًا﴾ មានន័យថា៖ "**សូមអ្នកធ្វើឱ្យពួកយើងមានព្រះផង។**(អាល់អាក់រ៉ហ្វ : ១៣៨)
មានសហការីខ្លះរបស់ណាពីបាននិយាយទៅកាន់គាត់ថា សូមលោកកំណត់យកដើមឈើ ហ្សាទូអាន់វ៉ាតជាទីសក្ការៈសម្រាប់ពួកយើង។
ណាពីបានស្បថថានេះដូចជាពាក្យសម្ដីរបស់អម្បូរអ៊ីស្រាអែល៖
﴿ ٱجۡعَل لَّنَآ إِلَٰهًا كَمَا لَهُمۡ ءَالِهَةٞ﴾ មានន័យថា៖ "**សូមអ្នកធ្វើឱ្យពួកយើងមានព្រះដូចពួកគេដែរ។** (អាល់អាក់រ៉ហ្វ : ១៣៨)

អាប់ឌន់ណាពី៖ តែអម្បូរអ៊ីស្រាអែលនិងពួកអ្នកដែលសុំឱ្យណាពីកំណត់យកដើមឈើដែលជាទីសក្ការៈសម្រាប់ពួកគេនោះ មិនបានក្លាយជាកាហ្វៀរដោយសាររឿងនោះទេ។

អាប់ឌល់ឡោះ៖ ចម្លើយគឺថា អម្បូរអ៊ីស្រាអែលនិងពួកអ្នកដែលសុំណាពី គឺពួកគេមិនទាន់បានធ្វើទេ។ ក៏ប៉ុន្តែ បើសិនជាពួកគេបានធ្វើ ច្បាស់ណាស់ពួកគេនឹងក្លាយជាកាហ្វៀរ។ ពួកអ្នកដែលណាពីបានហាមឃាត់ បើពួកគេមិនបានស្ដាប់បង្គាប់គាត់ ហើយមានអប្បិយជំនឿចំពោះដើមឈើនោះ គឺច្បាស់ណាស់ពួកគេនឹងក្លាយជាកាហ្វៀរ។

អាប់ឌន់ណាពី៖ តែខ្ញុំនៅមានបញ្ហាផ្សេងទៀត គឺរឿងអូសាម៉ះ ពិន ហ្សេត ដែលបានសម្លាប់ជនដែលបានពោលពាក្យសាក្សីថា «لا إله إلا الله» ហើយណាពីបានជំទាស់នឹងទង្វើរបស់គេដោយគាត់បានពោលថា « នែ! អូសាម៉ះ តើអ្នកសម្លាប់គេបន្ទាប់ពីគេបានពោលពាក្យសាក្សីថា «لا إله إلا الله» ឬ? ណាពីបានមានប្រសាសន៍ផងដែរថា "**គេប្រើឱ្យខ្ញុំប្រយុទ្ធប្រឆាំងនឹងមនុស្សរហូតដល់ពួកគេធ្វើសាក្សីថា «لا إله إلا الله»។**" តើខ្ញុំអាចសំយោគចូលគ្នារវាងពាក្យសម្ដីរបស់អ្នកនិងហាទីសទាំងពីរនេះយ៉ាងដូចម្ដេច? សូមជួយប្រាប់ខ្ញុំផង! សូម អល់ឡោះ ចង្អុលបង្ហាញផ្លូវដល់អ្នក។

អាប់ឌល់ឡោះ៖ តាមដែលធ្លាប់ដឹង ណាពីបានប្រយុទ្ធប្រឆាំងនឹងពួកជីហ្វ ហើយបានបណ្ដេញពួកគេ ខណៈដែលពួកគេបានពោលពាក្យសាក្សីនេះ។ សហការីរបស់





គាត់ក៏បានប្រយុទ្ធប្រឆាំងនឹងកុលសម្ព័ន្ធហានីហ្វះ ដ្បិតពួកគេបានពោលពាក្យសាក្សីនេះនិងសឡាត។ ដូចគ្នានឹង សៃទីណាអាលី បានដុតពួកគេ។ អ្នកឯកភាពថាអ្នកដែលប្រកែកនឹងការរស់ឡើងវិញគឺជាកាហ្វៀរ ហើយច្បាប់អនុញ្ញាតឱ្យសម្លាប់ ដ្បិតគេពោលសាក្សី។ អ្នកដែលប្រកែកនឹងរូកុនណាមួយក្នុងចំណោមរូកុនឥស្លាមទាំងប្រាំគឺក្លាយជាកាហ្វៀរ ហើយគេអនុញ្ញាតឱ្យសម្លាប់ ដ្បិតគេពោលពាក្យសាក្សី។ ពាក្យនេះគ្មានប្រយោជន៍សម្រាប់គេដោយការបដិសេធចំពោះមែកធាងនៃសាសនា ចុះរឿងអីចំពោះការបដិសេធនឹងឫសគល់នៃសាសនាបែរជាគ្មានបញ្ហាចំពោះគេវិញ? ក្រែងអ្នកមិនទាន់បានយល់ពីអត្ថន័យនៃហាទីសទាំងនេះទេដឹង។

រីឯ ហាទីសអូសាម៉ះ វិញ គាត់បានសម្លាប់បុរសម្នាក់ដែលបានអះអាងថាគេជាឥស្លាមពីព្រោះ អូសាម៉ះ បានគិតថាបុរសនោះពោលដោយសារខ្លាចបាត់បង់ជីវិតនិងទ្រព្យសម្បត្តិរបស់គេតែប៉ុណ្ណោះ។ ចំពោះបុគ្គលដែលបង្ហាញថាខ្លួនជាឥស្លាមត្រូវរក្សាគេរហូតដល់មានភស្តុតាងបញ្ជាក់ច្បាស់ថាគេបានធ្វើផ្ទុយពីឥស្លាម។ អល់ឡោះ បានមានព្រះបន្ទូលថា៖ ﴿يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُوٓاْ إِذَا ضَرَبۡتُمۡ فِي سَبِيلِ ٱللَّهِ فَتَبَيَّنُواْ﴾ មានន័យថា "**បណ្ដាអ្នកដែលមានជំនឿ កាលណាពួកអ្នកចេញដំណើរទៅធ្វើសង្គ្រាមក្នុងផ្លូវ អល់ឡោះ ចូរបញ្ជាក់ឱ្យច្បាស់។** (អាន់នីសាក : ៩៤)

ចូរបញ្ជាក់ឱ្យជាក់ច្បាស់។ អាយ៉ាត់នេះជាភស្តុតាងបញ្ជាក់ថាត្រូវបញ្ឈប់និងពិនិត្យឱ្យច្បាស់។ តែប្រសិនបើក្រោយមកមានអ្វីបញ្ជាក់ថាផ្ទុយនឹងឥស្លាម គឺគេអនុញ្ញាតឱ្យសម្លាប់ដោយព្រះបន្ទូលរបស់ទ្រង់ថា៖﴿فَتَبَيَّنُواْ﴾មានន័យថា៖ "**ចូរបញ្ជាក់ឱ្យជាក់ច្បាស់**"។ (អាន់នីសាក : ៩៤)

ហាទីសផ្សេងទៀតក៏ដូចគ្នាដែរ អត្ថន័យរបស់វាដូចអ្វីដែលខ្ញុំបាននិយាយអំពីចឹង។ អ្នកដែលមានតាវហេតនិងសាសនាឥស្លាមគឺចាំបាច់ត្រូវបញ្ឈប់ លើកលែងតែមានភស្តុតាងបញ្ជាក់ថាផ្ទុយពីរឿងទាំងអស់នោះ។ ភស្តុតាងបញ្ជាក់ពីរឿងទាំងនេះ អ្នកនាំសារ អល់ឡោះ បានមានប្រសាសន៍ថា៖ មានន័យថា "**តើអ្នកសម្លាប់គេបន្ទាប់ពីគេពោលពាក្យសាក្សីឬ?**"(អាល់ពូខរី)

គាត់បានមានប្រសាសន៍ទៀតដែរថា៖ មានន័យថា "**គេប្រើឱ្យខ្ញុំប្រយុទ្ធប្រឆាំងនឹងមនុស្សរហូតដល់ពួកគេពោលពាក្យសាក្សីថា «لا إله إلا الله» ។**(មូស្លីម)

គាត់បានមានប្រសាសន៍អំពីពួកខវ៉ារិច(ពួកបះបោរ)ថា៖ មានន័យថា៖ "**បើពួកអ្នកជួបពួកគេនៅកន្លែងណា ចូរពួកអ្នកសម្លាប់ពួកគេចុះ។**(អាល់ពូខរី)

ដ្បិតពួកគេជាអ្នកគោរពសក្ការៈ និងសូត្រធម៌(តះលីល)ច្រើន រហូតដល់ពួកសហាការីណាពីរិះគន់ខ្លួនឯងនៅពេលបានឃើញការគោរពសក្ការៈរបស់ពួកបះបោរនោះ។ ពួកគេបានរៀនពីសហាការីណាពី។ ពាក្យសាក្សី ការគោរពសក្ការៈ



ច្រើន ហើយការអះអាងថាខ្លួនជាឥស្លាមមិនអាចការពារពីការសម្លាប់បានឡើយ ដរាបណាមានភស្តុតាងបញ្ជាក់ថាពួកគេធ្វើផ្ទុយនឹងច្បាប់ឥស្លាម។

អាប់ឌន់ណាពី៖ តើអ្នកយល់យ៉ាងណាដែរទាក់ទងនឹងហាទីសណាពីថា នៅថ្ងៃបរលោក មនុស្សជាច្រើននាំគ្នាសុំណាពីអាដាំ ណួស អ៊ីបព្រហ៊ីម មូសា និងអ៊ីសា ឱ្យជួយ។ តែពួកគេមិនអាចជួយបានរហូតដល់ណាពីចុងក្រោយគេគឺណាពីមូហាំម៉ាត់។ នេះបញ្ជាក់ថាការសុំជំនួយពីអ្នកផ្សេងក្រៅពី អល់ឡោះ មិនមែនស្ទីរិកទេ។

អាប់ឌល់ឡោះ៖ នេះជាការយល់ខុសរបស់អ្នកពីជាតុពិតរបស់បញ្ហានេះ។ ការសុំជំនួយពីសត្វលោកមានជីវិតដែលមានលទ្ធភាព គឺយើងមិនជំទាស់ទេ។

ដូច អល់ឡោះ បានមានព្រះបន្ទូលថា៖ ﴿فَٱسۡتَغَٰثَهُ ٱلَّذِي مِن شِيعَتِهِۦ عَلَى ٱلَّذِي مِنۡ عَدُوِّهِۦ﴾

មានន័យថា **"បុរសដែលមកពីអម្បូររបស់មូសាសុំឱ្យមូសាជួយតទល់នឹងអ្នកដែលមកពីសត្រូវរបស់គេ។"** (អាល់ក៏សស់ : ១៥)

ដូចគ្នាដែរមនុស្សអាចសុំពីមិត្តរបស់ខ្លួនឱ្យជួយនៅពេលធ្វើសង្គ្រាមនិងប្រការផ្សេងទៀតដែលគេអាចជួយបាន។ តែយើងប្រកែកចំពោះអ្វីដែលពួកអ្នកកំពុងតែធ្វើវាដូចជាការសុំជំនួយពីផ្នូរវ៉ាលី ឬការអវត្តមានរបស់ពួកគេ ចំពោះអ្វីដែលគេគ្មានលទ្ធភាពធ្វើលើកលែងតែ អល់ឡោះ តែមួយគត់។ នៅថ្ងៃបរលោកមនុស្សបានសុំពីពួកណាពីឱ្យជួយ។ ពួកគេមានបំណងចង់ឱ្យពួកណាពីសុំពី អល់ឡោះ ឱ្យជំនុំជម្រះមនុស្ស ដើម្បីឱ្យពួកអ្នកដែលត្រូវចូលឋានសួគ៌បានរួចផុតពីទុក្ខលំបាកនៅឯវាលជួបជុំ(ម៉ះស្ហើរ)នោះ។ សុំបែបនេះគេអនុញ្ញាតនៅក្នុងលោកិយនិងនៅថ្ងៃបរលោក។ គឺទៅជួបកុសលបុគ្គលអង្គុយជាមួយគ្នា ហើយគាត់ស្តាប់សម្តីរបស់អ្នក។ អ្នកនិយាយទៅកាន់គេថាសូមលោកសុំពី អល់ឡោះ ឱ្យខ្ញុំផង។ ដូចដែលសហាការីរបស់ណាពីសុំពីគាត់កាលគាត់នៅរស់។ តែក្រោយពីគាត់ស្លាប់រួច គឺមិនអាចធ្វើបានទេ។ គាត់ដឹងពីអ្វីដែលពួកគេសុំពីផ្នូររបស់គាត់ តែបុព្វបុរសឥស្លាមបានហាមឃាត់ពីការសុំពី អល់ឡោះ នៅក្បែរផ្នូរ។

អាប់ឌន់ណាពី៖ តើអ្នកយល់យ៉ាងម៉េចដែរចំពោះរឿងរបស់ អ៊ីបព្រហ៊ីម នៅពេលដែលគេបោះគាត់ទៅក្នុងភ្លើង? ហើយ ជីព្រីល បានបង្ហាញខ្លួននៅលើអាកាសបន្ទាប់មកសួរគាត់ថា តើអ្នកមានអ្វីចង់ឱ្យខ្ញុំជួយទេ? អ៊ីបព្រហ៊ីម បាននិយាយថា "ចំពោះអ្នក ខ្ញុំមិនត្រូវការទេ" បើការសុំជំនួយពី ជីបព្រៀលស្ទីរិក មែននោះ ច្បាស់ជា ជីព្រីល មិនបង្ហាញខ្លួននៅចំពោះមុខ អ៊ីបព្រហ៊ីម នោះទេ!

អាប់ឌល់ឡោះ៖ នេះគឺជាការយល់ច្រឡំទី១ ហើយហាទីសនេះមិនត្រឹមត្រូវនោះទេ។ យើងសន្មតថាវាត្រឹមត្រូវ គឺ ជីព្រីល បានបង្ហាញខ្លួននៅចំពោះមុខ អ៊ីបព្រហ៊ីមនិងជួយតាមអ្វីដែលគេមានលទ្ធភាពអាចជួយបាន។ ត្រូវនឹងព្រះបន្ទូលរបស់ អល់




ឡោះ ថា៖ ﴿عَلَّمَهُۥ شَدِيدُ ٱلْقُوَىٰ﴾ មានន័យថា "**អ្នកដែលមានកម្លាំងខ្លាំងក្លា(ជីព្រីល) បានបង្រៀនគេ(ណាពី)។**" (អាន់នាជម៍ : ៥)

បើសិនជា អល់ឡោះ អនុញ្ញាតឱ្យគេយកភ្លើងដែលកំពុងឆេះ អ៊ីបព្រហ៊ីម ព្រម ទាំងដីនិងភ្នំដែលនៅជុំវិញ អ៊ីបព្រហ៊ីម ទៅបោះចោលនៅទិសខាងកើតឬទិស ខាងលិច ច្បាស់គឺគ្មានអ្វីធ្វើឱ្យ ជីព្រីល ធ្វើមិនកើតនោះទេ។ ដូចគ្នាដែរ បុរសអ្នក មានម្នាក់បង្ហាញខ្លួននៅចំពោះមុខអ្នកក្រខ្វះខាតម្នាក់ ហើយឱ្យលុយគាត់ដើម្បី បំពេញតម្រូវការរបស់គាត់។ តែគេបដិសេធ ហើយអត់ធ្មត់រហូតដល់ អល់ឡោះ បានប្រទានលាភសក្ការៈដល់គេដែលពុំមែនជាសគុណរបស់នរណាម្នាក់។ បើប្រៀប ធៀបទង្វើនេះនឹងការសុំជំនួយដែលជាការគោរពសក្ការៈនិងស្ហ៊ីរិក ដែលអ្នកកំពុង តែធ្វើនាពេលបច្ចុប្បន្ននេះ តើវាខុសគ្នាកម្រិតណា? ចូរជ្រាបចុះថា! ពួកមនុស្ស ជំនាន់មុនដែលគេបញ្ជូនណាពីមកគឺដើម្បីអំពើស្ហ៊ីរិករបស់ពួកគេស្រាលជាងអំពើ ស្ហ៊ីរិកនៅសម័យបច្ចុប្បន្ននេះបីប្រការ៖

ទី១ មនុស្សជំនាន់មុនមិនធ្វើស្ហ៊ីរិកចំពោះ អល់ឡោះ ទេលើកលែងតែនៅពេល ជីវិតរបស់ពួកគេរស់នៅសុខសប្បាយ។ តែបើពួកគេមានទុក្ខលំបាក ពួកគេ ប្រតិបត្តិសាសនាចំពោះ អល់ឡោះ ដោយចិត្តស្មោះត្រង់ និងមានភក្តីភាពចំពោះ ទ្រង់។ ភស្តុតាងបញ្ជាក់ដោយព្រះបន្ទូលរបស់ អល់ឡោះ ថា៖

﴿فَإِذَا رَكِبُوا۟ فِى ٱلْفُلْكِ دَعَوُا۟ ٱللَّهَ مُخْلِصِينَ لَهُ ٱلدِّينَ فَلَمَّا نَجَّىٰهُمْ إِلَى ٱلْبَرِّ إِذَا هُمْ يُشْرِكُونَ﴾ មានន័យថា "**នៅពេលពួកគេជិះសំពៅ(ជួបប្រទះនឹងគ្រោះថ្នាក់) ពួកគេបួងសួងសុំចំពោះ អល់ឡោះ ដោយចិត្តស្មោះសក្នុងការប្រណិប័តន៍ចំពោះទ្រង់។ តែនៅពេលទ្រង់បានសង្គ្រោះពួកគេដល់ត្រើយ ពេលនោះពួកគេបែរជាធ្វើស្ហ៊ីរិកចំពោះទ្រង់។**"(អាល់អាំងកើពូត : ៦៥)

ទ្រង់បានបន្តទៀតថា៖

﴿وَإِذَا غَشِيَهُم مَّوْجٌ كَٱلظُّلَلِ دَعَوُا۟ ٱللَّهَ مُخْلِصِينَ لَهُ ٱلدِّينَ فَلَمَّا نَجَّىٰهُمْ إِلَى ٱلْبَرِّ فَمِنْهُم مُّقْتَصِدٌ وَمَا يَجْحَدُ بِـَٔايَٰتِنَآ إِلَّا كُلُّ خَتَّارٍ كَفُورٍ﴾

មានន័យថា "**នៅពេលរលកសមុទ្របក់បោកមកគ្របលើពួកគេ(ពួកស្ហ៊ីរិក)ដូចជាផ្ទាំងពពកងងឹត។ ពួកគេបានបួងសួងសុំពី អល់ឡោះ ដោយចិត្តស្មោះសក្នុងការប្រតិបត្តិទៅចំពោះទ្រង់។ តែនៅពេលដែលទ្រង់សង្គ្រោះពួកគេដល់ត្រើយ ពួកគេខ្លះរមិលគុណចំពោះទ្រង់។ គ្មានអ្នកណាម្នាក់បដិសេធនឹងនិមិត្តសញ្ញារបស់យើងក្រៅពីពួកអ្នកដែលក្បត់និងប្រឆាំងឡើយ។**" (លុកម៉ាន : ៣២)

ក្រុមស្ហ៊ីរិកដែលណាពីបានប្រយុទ្ធប្រឆាំងនឹងពួកគេ គឺពួកគេបានសុំចំពោះ អល់ ឡោះ ហើយសុំចំពោះអ្នកដទៃនៅពេលមានសុខសន្តិភាព។ តែនៅពេលមានទុក្ខ លំបាក ពួកគេសុំពី អល់ឡោះ តែមួយគត់។ ពួកគេបានបំភ្លេចចៅហ្វាយនាយ



របស់ពួកគេ។ រីឯពួកមុស្ររីគីននៅសម័យយើងវិញ ពួកគេសុំពីអ្នកដទៃផ្សេងពី អល់ឡោះ ទាំងពេលមានសេចក្តីសុខនិងពេលមានទុក្ខលំបាក។ បើនរណាម្នាក់ក្នុងចំណោមពួកគេមានទុក្ខលំបាក គេនិយាយថា បពិត្រអ្នកនាំសារ អល់ឡោះ ហ៊ូសេន និងអ្នកដទៃផ្សេងទៀត។ តើនៅឯណាអ្នកដែលយល់ពីរឿងរ៉ាវទាំងនោះ?

**ទី២ មនុស្សជំនាន់មុន**សុំពី អល់ឡោះ តាមរយៈមនុស្សដែលនៅជិត អល់ឡោះ តាមរយៈណាពី ឬវ៉ាលី ឬទេវតា ឬយ៉ាងហោចបំផុតគឺដុំថ្មឬដើមឈើ ដែលប្រតិបត្តិចំពោះ អល់ឡោះ មិនប្រឆាំងចំពោះទ្រង់ឡើយ។ តែនៅសម័យយើងវិញ ពួកគេបួងសួងចំពោះ អល់ឡោះ តាមរយៈមនុស្សដែលមានពុតត្បុតខ្លាំងបំផុត។ អ្នកដែលមានគោលជំនឿត្រឹមត្រូវ ហើយមិនដែលប្រឆាំងដូចជាដុំថ្មដើមឈើ ងាយស្រួលជាងអ្នកដែលមានជំនឿចំពោះអ្នកដែលគេដឹងជាទូទៅថាជាមនុស្សមានពុតត្បុតនិងអាក្រក់ជួជាតិ។

**ទី៣ ពួកមុស្ររីគីននៅសម័យ**ណាពី

តាមពិតពួកគេស្ទីរិកចំពោះតាវហេតភាពជាព្រះដែលត្រូវគេគោរព ហើយពួកគេមិនស្ទីរិកចំពោះតាវហេតភាពជាម្ចាស់របស់ អល់ឡោះ នោះទេ។ ផ្ទុយពីស្ទីរិករបស់ពួកអ្នកជំនាន់ក្រោយ។ ពិតណាស់ អំពើស្ទីរិកនេះភាគច្រើនកើតឡើងចំពោះតាវហេតភាពជាម្ចាស់របស់ អល់ឡោះ (រូពូពីយ៉ះ)។ ក៏ដូចគ្នាដែរ កើតឡើងចំពោះតាវហេតភាពជាព្រះដែលត្រូវគេគោរពសក្ការះរបស់ អល់ឡោះ (អ៊ូលូហ៊ីយ៉ះ)។ ឧទាហរណ៍ ពួកគេចាត់ទុកធម្មជាតិជាអ្នកចាត់ចែងនិងរៀបចំនៅក្នុងចក្រវាលទាំងមូលចំពោះការរស់និងការស្លាប់។ល។

សង្ឃឹមថា ខ្ញុំនឹងបញ្ចប់ពាក្យពេចន៍របស់ខ្ញុំដោយលើកយកបញ្ហាដ៏ធំមួយធ្វើឱ្យអ្នកយល់នូវអ្វីដែលបានលើកឡើងខាងលើ។ គឺគ្មានការខ្វែងគំនិតគ្នាទេចំពោះតាវហេតដែលជាជំនឿក្នុងចិត្ត ពោលដោយអណ្តាត អនុវត្តដោយកាយវិការ។ បើសិនជាមានអ្វីមួយខ្វះចន្លោះក្នុងចំណោមប្រការទាំងនេះ គឺគេមិនចាត់ទុកជាបុគ្គលមូស្លីមទេ។ បើសិនជាគេស្គាល់តាវហេត តែគេមិនបានអនុវត្តតាម គឺគេជាកាហ្វៀរចចេសរឹងរូសដូចហ្វៀរឱននិងអ៊ីបលីស។ ត្រង់នេះគឺមានមនុស្សជាច្រើនយល់ខុស។ ពួកគេនិយាយថា នេះជាការពិត តែយើងគ្មានសមត្ថភាពធ្វើទេ។ គេមិនអនុញ្ញាតនៅក្នុងប្រទេសរបស់យើងជាមួយជនជាតិរបស់យើង។ ចាំបាច់ត្រូវតែសម្របខ្លួនជាមួយនឹងពួកគេ ត្រូវអែបអបជាមួយពួកគេខ្លាចក្រែងអំពើអាក្រក់របស់ពួកគេ។ បុគ្គលកម្សត់ម្នាក់នេះមិនដឹងថាមេដឹកនាំពួកកាហ្វៀរភាគច្រើនដឹងការពិត ហើយពួកគេបានបោះបង់ការពិតដោយសារលេសនេះលេសនោះ។ អល់ឡោះ បានមានព្រះបន្ទូលថា៖

﴿اشْتَرَوْا بِآيَاتِ اللَّهِ ثَمَنًا قَلِيلًا فَصَدُّوا عَن سَبِيلِهِ ۚ إِنَّهُمْ سَاءَ مَا كَانُوا يَعْمَلُونَ﴾ មានន័យថា “**ពួកគេ**

បានប្តូរអាយ៉ាត់ៗរបស់ អល់ឡោះ ដោយសម្បត្តិលោកិយតិចតួច ហើយពួកគេបានរាំងអ្នកដទៃពីផ្លូវរបស់ទ្រង់។ ពិតណាស់អ្វីដែលពួកគេប្រព្រឹត្តគឺអាក្រក់បំផុត។"(អាត់តៅហ្ពះ : ៩)

ចំពោះអ្នកដែលអនុវត្តតាវហេតតែរូបភាពខាងក្រៅ ហើយក្នុងចិត្តគ្មានជំនឿ គឺជាមូណាហ្វិក។ វាអាក្រក់ជាងពួកកាហ្វៀរដោយ អល់ឡោះ បានមានព្រះបន្ទូលថា៖ ﴿إِنَّ ٱلْمُنَٰفِقِينَ فِى ٱلدَّرْكِ ٱلْأَسْفَلِ مِنَ ٱلنَّارِ﴾ មានន័យថា "ពិតណាស់ ពួកអ្នកពុតត្បុតទាំងនោះគឺស្ថិតនៅបាតក្រោមបំផុតនៃឋាននរក ហើយអ្នក(មូហាំម៉ាត់)នឹងមិនបានឃើញអ្នកណាម្នាក់ជួយពួកគេនោះឡើយ។"(អាន់នីសាក : ១៤៥)

បញ្ហានេះបញ្ជាក់យ៉ាងច្បាស់ចំពោះអ្នក។ បើសិនជាអ្នកពិនិត្យសង្កេតទៅលើសម្តីរបស់មនុស្ស អ្នកនឹងឃើញថាអ្នកដែលដឹងការពិត ហើយមិនបានអនុវត្តតាមដោយសារខ្លាចបាត់បង់សម្បត្តិលោកិយដូចករូន ឬបុណ្យស័ក្តិដូចហាម៉ាន ឬ អំណាចដូចហ្វៀរឱន។

អ្នកនឹងឃើញអ្នកដែលអនុវត្តតែរូបភាពខាងក្រៅ មិនមែនក្នុងចិត្តដូចជាពួកពុតត្បុត់ បើសិនជាអ្នកសួរពីជំនឿក្នុងចិត្តរបស់គេ គឺច្បាស់ជាមិនដឹងនោះទេ។

**ក៏ប៉ុន្តែអ្នកត្រូវយល់ពីអាយ៉ាត់ទាំងពីរនេះ៖**

អាយ៉ាត់ទី១: ដូចដែលបាននិយាយកន្លងមក គឺព្រះបន្ទូលរបស់ អល់ឡោះ ថា៖ ﴿لَا تَعْتَذِرُوا۟ قَدْ كَفَرْتُم بَعْدَ إِيمَٰنِكُمْ﴾ មានន័យថា "ពួកអ្នកមិនចាំបាច់ដោះសារទេ។ ពិតណាស់ ពួកអ្នកបានប្រឆាំងបន្ទាប់ពីពួកអ្នកមានជំនឿរួច។"(អាត់តៅហ្ពះ : ៦៦)

បើអ្នកបានដឹងថាអ្នកដែលបានចូលរួមជាមួយអ្នកនាំសាររបស់ អល់ឡោះ ក្នុងការធ្វើសង្គ្រាមប្រឆាំងនឹងពួករូម។ ពួកគេបានក្លាយជាអ្នកកាហ្វៀរដោយសារសម្តីលេងសើចរបស់ពួកគេ។ នេះបញ្ជាក់ប្រាប់អ្នកយ៉ាងច្បាស់ថាអ្នកដែលនិយាយពាក្យគូហ្វរ ឬអនុវត្តប្រការគូហ្វរដោយសារខ្លាចបាត់បង់ទ្រព្យសម្បត្តិឬបុណ្យស័ក្តិ ឬផ្គាប់ចិត្តនរណាម្នាក់។ ពិតជាធ្ងន់ធ្ងរជាងអ្នកដែលនិយាយពាក្យសម្តីលេងសើច។ ពីព្រោះគោលបំណងនៃពាក្យសម្តីលេងសើចរបស់គេគឺដើម្បីឱ្យមនុស្សសើចសប្បាយតែប៉ុណ្ណោះ។ រីឯអ្នកដែលនិយាយពាក្យសម្តីគូហ្វរ ឬអនុវត្តតាមដោយសារការខ្លាច ឬចង់បានលាភសក្ការៈពីសត្វលោក ពិតណាស់គេមានជំនឿចំពោះការសន្យារបស់ពួកបិសាចស្ហៃតន។ អល់ឡោះ បានមានព្រះបន្ទូលថា៖ ﴿ٱلشَّيْطَٰنُ يَعِدُكُمُ ٱلْفَقْرَ وَيَأْمُرُكُم بِٱلْفَحْشَآءِ﴾ មានន័យថា "ស្ហៃតនបំភ័យពួកអ្នកពីភាពក្រីក្រនិងជំរុញពួកអ្នកឱ្យប្រព្រឹត្តអំពើអបាយមុខ។"(អាល់ហ្បាគរ៉ោះ : ២៦៨)

គេភ័យខ្លាចចំពោះការគំរាមបំភ័យរបស់ស្ហៃតន៖ ﴿إِنَّمَا ذَٰلِكُمُ ٱلشَّيْطَٰنُ يُخَوِّفُ أَوْلِيَآءَهُۥ﴾ មានន័យថា "ពិតណាស់ អ្នកដែលធ្វើឱ្យពួកអ្នកខកចិត្តគឺស្ហៃតនបំភិតបំភ័យពួក



អ្នកគាំទ្រវា។" (អាលីអ៊ីមរ៉ន : ១៧៥)
គេមិនជឿចំពោះម្ចាស់ដ៏មហាមេត្តាដោយពាក្យសន្យារបស់ទ្រង់៖
﴿وَٱللَّهُ يَعِدُكُم مَّغۡفِرَةٗ مِّنۡهُ وَفَضۡلٗا﴾ មានន័យថា "អល់ឡោះ បានសន្យានឹងពួកអ្នកនូវការលើកលែងទោសពីទ្រង់និងក្តីប្រទាន។" (អាល់ហ្គោគរ៉ោះ : ២៦៨)
គេមិនខ្លាចពីការគំរាមរបស់ អល់ឡោះ ដ៏មានអំណាចខ្លាំងក្លា៖
﴿فَلَا تَخَافُوهُمۡ وَخَافُونِ إِن كُنتُم مُّؤۡمِنِينَ﴾ មានន័យថា "ចូរកុំខ្លាចពួកគេ តែពួកអ្នកត្រូវខ្លាចយើងវិញ!"(អាលីអ៊ីមរ៉ន : ១៧៥)
តើស្ថានភាពបែបនេះគេស័ក្តិសមជាវ៉ាលីរបស់ អល់ឡោះ ឬជាវ៉ាលីរបស់ ស្ហៃតន?
អាយ៉ាត់ទី២ : អល់ឡោះ បានមានព្រះបន្ទូលថា៖
﴿مَن كَفَرَ بِٱللَّهِ مِنۢ بَعۡدِ إِيمَٰنِهِۦٓ إِلَّا مَنۡ أُكۡرِهَ وَقَلۡبُهُۥ مُطۡمَئِنُّۢ بِٱلۡإِيمَٰنِ وَلَٰكِن مَّن شَرَحَ بِٱلۡكُفۡرِ صَدۡرٗا فَعَلَيۡهِمۡ غَضَبٞ مِّنَ ٱللَّهِ وَلَهُمۡ عَذَابٌ عَظِيمٞ﴾
មានន័យថា "នរណាបានប្រឆាំងនឹង អល់ឡោះ បន្ទាប់ពីមានជំនឿរួចនោះ(គេនឹងទទួលបានការខឹងសម្បាពី អល់ឡោះ) លើកលែងអ្នកដែលត្រូវគេបង្ខិតបង្ខំ ហើយចិត្តរបស់គេស្ងប់ស្ងប់ស្ងល់នឹងជំនឿ។ ប៉ុន្តែ អ្នកណាដែលបើកចិត្តទទួលជំនឿគឺពួកគេនឹងទទួលការខឹងសម្បាពី អល់ឡោះ ហើយពួកគេនឹងទទួលទារុណកម្មយ៉ាងធ្ងន់ធ្ងរបំផុត។"(អាន់ណាហល៍ : ១០៦)
អល់ឡោះ មិនអធ្យាស្រ័យចំពោះពួកគេលើកលែងតែអ្នកត្រូវគេបង្ខិតបង្ខំ ហើយចិត្តរបស់គេស្ងប់ស្ងប់ស្ងល់នឹងជំនឿ។ ចំណែកអ្នកដទៃទៀតគឺកាហ្វៀរសូម្បីតែគេធ្វើដោយការភ័យខ្លាច ឬដោយចេតនា ឬវេការបង្ខិតបង្ខំពីនរណាម្នាក់ ឬផ្គាប់ចិត្តនរណាម្នាក់ ឬទឹកដីនិយម គ្រួសារនិយម ឬត្រកូលនិយម ឬទ្រព្យសម្បត្តិនិយម ឬគេប្រព្រឹត្តដោយកំប្លែងលេង ឬក្នុងបំណងផ្សេងៗទៀត។ លើកលែងតែអ្នកដែលត្រូវគេបង្ខិតបង្ខំ។ អាយ៉ាត់នេះបញ្ជាក់ថាមនុស្សមិនត្រូវគេបង្ខិតបង្ខំទេ លើកលែងតែតាមរយៈពាក្យសម្តីឬកាយវិការ។ រីឯគោលជំនឿក្នុងចិត្តគ្មាននរណាម្នាក់អាចបង្ខិតបង្ខំបានឡើយ។ អល់ឡោះ បានមានព្រះបន្ទូលថា៖
﴿ذَٰلِكَ بِأَنَّهُمُ ٱسۡتَحَبُّواْ ٱلۡحَيَوٰةَ ٱلدُّنۡيَا عَلَى ٱلۡأٓخِرَةِ وَأَنَّ ٱللَّهَ لَا يَهۡدِي ٱلۡقَوۡمَ ٱلۡكَٰفِرِينَ﴾មានន័យថា "នោះដោយសារតែពួកគេស្រឡាញ់ការរស់នៅក្នុងលោកិយជាងថ្ងៃបរលោក។ ពិតណាស់ អល់ឡោះ មិនចង្អុលបង្ហាញដល់ក្រុមដែលគ្មានជំនឿនោះទេ។" (អាន់ណាហល៍ : ១០៧)
ទ្រង់បានប្រកាសយ៉ាងច្បាស់ថាទារុណកម្មនេះមិនបណ្តាលមកពីគោលជំនឿ ភាពល្ងង់ខ្លៅ និងការស្អប់ខ្ពើមសាសនា ឬស្រឡាញ់អំពើគូហ្វរនោះទេ តែបណ្តាលមកពីការស្រឡាញ់ការរស់នៅក្នុងលោកិយ ហើយឱ្យតម្លៃលោកិយខ្លាំងជាងសាស




នា។ អល់ឡោះ ជាម្ចាស់មហាដឹង។

**បន្ទាប់ពីការបកស្រាយទាំងនេះ** តើមិនទាន់ដល់ពេលអ្នក( សូម អល់ឡោះ ចង្អុលបង្ហាញដល់អ្នក )ត្រូវសារភាពកំហុស និងត្រឡប់ទៅរកទ្រង់ព្រមដោយបោះបង់ចោលនូវអ្វីដែលអ្នកកំពុងធ្វើ។ អ្វីៗដូចដែលអ្នកបានឮអ៊ីចឹង។ វាគ្រោះថ្នាក់ខ្លាំងណាស់។ វាជាបញ្ហាធំ។ គឺជាអត្ថបទដ៏ថ្លៃថ្លា។

អាប់ឌុន់ណាពី៖ ខ្ញុំសុំអភ័យទោសពី អល់ឡោះ និងសារភាពកំហុសចំពោះទ្រង់។ ខ្ញុំអះអាងថាគ្មានទេម្ចាស់ដ៏ពិតប្រាកដគឺមានតែ អល់ឡោះ ហើយ មូហាំម៉ាត់ ជាអ្នកនាំសាររបស់ អល់ឡោះ។ ពិតណាស់ ពីមុនខ្ញុំធ្លាប់ក្លាយជាកាហ្វៀរដោយសារខ្ញុំគោរពសក្ការៈផ្សេងពី អល់ឡោះ។ ខ្ញុំសុំពី អល់ឡោះ មេត្តាអភ័យទោសដល់ខ្ញុំនូវរាល់ទង្វើដែលខ្ញុំបានប្រព្រឹត្តកន្លងមក។ សូមទ្រង់មេត្តាអធ្យាស្រ័យ អភ័យទោសនិងករុណារបស់ទ្រង់ចំពោះខ្ញុំ។ សូមទ្រង់ពង្រឹងជំនឿតាវហេតនិងគោលជំនឿដ៏ត្រឹមត្រូវរហូតដល់ពេលទៅជួបទ្រង់។ សូមទ្រង់មេត្តាតបស្នងល្អដល់អ្នក។ នែ!អាប់ឌុល់ឡោះ ចំពោះពាក្យទូន្មានទាំងនេះព្រោះសាសនាគឺជាការទូន្មាន និងចំពោះការរារាំងរបស់អ្នកចំពោះអ្វីដែលខ្ញុំកំពុងធ្វើ។ គឺឈ្មោះរបស់ខ្ញុំ អាប់ឌុន់ណាពី ហើយខ្ញុំចង់ប្រាប់អ្នកថាខ្ញុំប្តូរឈ្មោះខ្ញុំជា អាប់ឌុល់រ៉ោះម៉ាន។ម្យ៉ាងទៀត សូមអរគុណលើការរារាំងរបស់អ្នកចំពោះអំពើអាក្រក់ផ្នែកផ្លូវចិត្តដែលខ្ញុំធ្វើកន្លងមក គឺគោលជំនឿវង្វេង បើសិនជាខ្ញុំទៅជួប អល់ឡោះ ទាំងមានជំនឿអ៊ីចឹងនោះ ខ្ញុំច្បាស់ជាបរាជ័យជារៀងរហូត។ តែខ្ញុំចង់សុំពីអ្នកចុងក្រោយ គឺសូមអ្នករំឭកខ្ញុំពីអំពើអាក្រក់មួយចំនួនដែលមនុស្សកំពុងតែយល់ច្រឡំ។

អាប់ឌុល់ឡោះ៖ អត់អីទេ! សូមអ្នកស្តាប់ខ្ញុំ។

❖ ចូរប្រុងប្រយ័ត្នចំពោះអត្តសញ្ញាណរបស់អ្នក កុំឱ្យវាខុសនឹងអ្វីដែលមាននៅក្នុងគម្ពីរអាល់គួរអាននិងស៊ុណ្ណះ។ កាន់តាមអ្វីដែលមានការខ្វែងយោបល់គ្នាមានចេតនាបង្កវិបត្តិ និងបង្វែរន័យដើមរបស់វា។ តាមពិតគ្មាននរណាដឹងពីការបកស្រាយអត្ថន័យរបស់ទ្រង់លើកលែងតែ អល់ឡោះ។ អត្តសញ្ញាណរបស់អ្នកចាំបាច់ត្រូវតែមានឫសគល់រឹងមាំផ្នែកចំណេះដឹង អ្នកត្រូវឋិតក្នុងចំណោមពួកអ្នកដែលនិយាយចំពោះចំណុចសង្ស័យថា៖ ﴿ءَامَنَّا بِهِۦ كُلٌّ مِّنۡ عِندِ رَبِّنَا﴾ មានន័យថា "**ពួកយើងខ្ញុំមានជំនឿចំពោះវា។ ទាំងអស់សុទ្ធតែមកពីម្ចាស់របស់ពួកយើងខ្ញុំ។**" (អាលីអ៊ីមរ៉ន : ៧)

ក្នុងបញ្ហាទំនាស់និងការខ្វែងយោបល់គ្នា ដូចអ្នកនាំសារបានមានប្រសាសន៍ថា៖ "**ចូរអ្នកបោះបង់នូវប្រការដែលអ្នកសង្ស័យ ហើយទៅរកប្រការដែលអ្នកមិនសង្ស័យ។**" (អះម៉ាត់ និងអាត់តៀរមីហ្ស៊ី)

ណាពីបានមានប្រសាសន៍ទៀតថា៖ មានន័យថា "**ជនណាបានការពារពីប្រការសង្ស័យ**




គឺគេបានការពារសាសនានិងកេរ្តិ៍ឈ្មោះរបស់គេ ហើយជនណាបានធ្លាក់ទៅក្នុងប្រការសង្ស័យ គឺគេធ្លាក់ក្នុងប្រការហារ៉ាម។” (អាល់ពូខរី និងមូស្លីម)
គាត់បន្តទៀតថា៖ មានន័យថា “អំពើបាបគឺជាអ្វីដែលធ្វើចំបែងចិត្តរបស់អ្នក ហើយអ្នកមិនចង់ឱ្យអ្នកដទៃដឹងវា។” (មូស្លីម)
គាត់បន្តទៀតថា៖ មានន័យថា “ចូរពិគ្រោះចិត្តរបស់អ្នក! ចូរពិគ្រោះខ្លួនឯងចំនួនបីដង! អំពើល្អគឺអ្វីដែលធ្វើឱ្យចិត្តរបស់អ្នកស្កប់ស្កល់ ហើយអំពើបាបគឺអ្វីដែលធ្វើឱ្យអ្នកចំបែងចិត្ត និងសង្ស័យនៅក្នុងទ្រូង។ បើទោះជាអ្នកដទៃគេផ្តល់យោបល់ឱ្យអ្នកយ៉ាងណាក៏ដោយ។” (អះម៉ាត់)

❖ ចូរកុំធ្វើតាមចំណង់តណ្ហា។ ជាការពិតណាស់ អល់ឡោះ បានដាស់តឿនចំពោះរឿងនេះដូចទ្រង់បានមានព្រះបន្ទូលថា៖ ﴿أَرَءَيْتَ مَنِ ٱتَّخَذَ إِلَٰهَهُۥ هَوَىٰهُ﴾ មានន័យថា “តើអ្នក(មូហាំម៉ាត់)ឃើញអ្នកដែលយកចំណង់តណ្ហារបស់គេធ្វើជាព្រះរបស់ខ្លួន?(អាល់ហ្វូរកន : ៤៣)

❖ ចូរកុំនិយមបុគ្គលនឹងទស្សនៈនិងទំនៀមទម្លាប់ជីដូនជីតារបស់ពួកអ្នក។ ព្រោះវារារាំងអ្នកពីការពិត។ ពិតណាស់ ការពិតគឺជារបស់បាត់ដែលអ្នកមានជំនឿកំពុងតែរក ទោះបីជានៅទីកន្លែងណាក៏ដោយ។ អ្នកមានជំនឿចាំបាច់ត្រូវតែរកការពិត។ អល់ឡោះ បានមានព្រះបន្ទូលថា៖

﴿وَإِذَا قِيلَ لَهُمُ ٱتَّبِعُوا۟ مَآ أَنزَلَ ٱللَّهُ قَالُوا۟ بَلْ نَتَّبِعُ مَآ أَلْفَيْنَا عَلَيْهِ ءَابَآءَنَآ ۗ أَوَلَوْ كَانَ ءَابَآؤُهُمْ لَا يَعْقِلُونَ شَيْـًٔا وَلَا يَهْتَدُونَ﴾

មានន័យថា “នៅពេលគេនិយាយទៅកាន់ពួកគេថា ចូរពួកអ្នកប្រតិបត្តិតាមអ្វីដែល អល់ឡោះ បានបញ្ចុះមក(គម្ពីរគួរអាន)។ ពួកគេបានឆ្លើយតបវិញថា ទេ! ពួកយើងតាមតែអ្វីដែលជាកេរ្តិ៍ដូនតារបស់ពួកយើងតែប៉ុណ្ណោះ។ តើពួកគេតាមដែរឬ បើសិនជាជីដូនជីតារបស់ពួកគេមិនយល់ដឹងនិងគ្មានការចង្អុលបង្ហាញ?”
(អាល់ហ្គោគ៉ោះ : ១៧០)

❖ ចូរប្រុងប្រយ័ត្ន! កុំប្រដូចខ្លួននឹងពួកកាហ្វៀរ ពីព្រោះវាជាប្រភពនៃសេចក្តីទុក្ខព្រួយទាំងឡាយ។ ណាពីបានមានប្រសាសន៍ថា៖ មានន័យថា “ជនណាបានប្រដូចខ្លួននឹងក្រុមណាមួយគឺគេឋិតក្នុងក្រុមនោះ។” (អាពូទើវ៉ូទ)

❖ ចូរប្រុងប្រយ័ត្ន! កុំប្រគល់សេចក្តីទុកចិត្តចំពោះអ្នកដទៃក្រៅពី អល់ឡោះ។ អល់ឡោះ បានមានព្រះបន្ទូលថា៖﴿وَمَن يَتَوَكَّلْ عَلَى ٱللَّهِ فَهُوَ حَسْبُهُۥٓ﴾ មានន័យថា “អ្នកណាប្រគល់សេចក្តីទុកចិត្តចំពោះ អល់ឡោះ គឺទ្រង់គ្រប់គ្រាន់សម្រាប់គេ។” (អាត់តឡើក : ៣)

❖ ចូរកុំស្តាប់បង្គាប់តាមមនុស្សលោកក្នុងការល្មើសនឹង អល់ឡោះ។រ៉សូលុលឡោះបានមានប្រសាសន៍ថា៖ មានន័យថា “គ្មានការស្តាប់បង្គាប់សត្វលោកក្នុង




**អំពើល្មើសនឹងម្ចាស់ដែលជាអ្នកបង្កើតសត្វលោកទេ។**”(អាត់តៀរមីហ្សី)

❖ ចូរប្រុងប្រយ័ត្ន! កុំសង្ការអាក្រក់ចំពោះ អល់ឡោះ។ អល់ឡោះ បានមានព្រះបន្ទូលក្នុងហាទីសកុឌស៊ីយ៍ថា៖ មានន័យថា “**យើងតបស្នងឱ្យខ្ញុំរបស់យើងតាមការសង្ការបស់គេចំពោះយើង។**”(អាល់ពូខរី និងមូស្លីម)

❖ ចូរប្រុងប្រយ័ត្ន! កុំពាក់ខ្សែគាថា ឬអំបោះ និងរបស់ផ្សេងទៀត ដើម្បីការពារគ្រោះថ្នាក់មុននឹងកើតឡើង ឬការពារមិនឱ្យមានគ្រោះថ្នាក់។

❖ ចូរប្រុងប្រយ័ត្ន! កុំពាក់ខ្សែចង្កេះដើម្បីការពារជំងឺក្តៅភ្នែក ពីព្រោះវាជាប្រការស្ទីរិក។ ណាពីបានមានប្រសាសន៍ថា៖ មានន័យថា “**ជនណាពាក់អ្វីមួយ គឺគេទុកជននោះចោលជាមួយនឹងរបស់នោះ**»។(អាត់តៀរមីហ្សី)

❖ ចូរប្រុងប្រយ័ត្ន! កុំសុំពរជ័យពីដុំថ្ម ដើមឈើ វត្ថុស័ក្តិសិទ្ធិ និងប្រាសាទបុរាណ ពីព្រោះវាជាអំពើស្ទីរិក។

❖ ចូរប្រុងប្រយ័ត្ន! កុំជឿលើប្រផ្នូលល្អអាក្រក់នៃអ្វីគ្រប់យ៉ាង ពីព្រោះវាជាអំពើស្ទីរិក។ ណាពីបានមានប្រសាសន៍ថា៖ មានន័យថា “**ជឿលើប្រផ្នូលគឺស្ទីរិក ជឿលើប្រផ្នូលគឺស្ទីរិកចំនួនបីដង។**” (អាពូទើវ៉ូទ)

❖ ចូរប្រុងប្រយ័ត្ន! កុំជឿគ្រូមន្តអាគមនិងគ្រូទាយដែលពួកគេអះអាងថាដឹងរឿងប្រការអាថ៌កំបាំង។ ពួកគេមើលក្បួនទាយតាមជើងលេខឃើញថា សំណាងល្អឬសំណាងអាក្រក់។ ជឿសម្តីពួកគេជាអំពើស្ទីរិក ពីព្រោះគ្មាននរណាម្នាក់ដឹងពីប្រការអាថ៌កំបាំងទេលើកលែងតែ អល់ឡោះ តែមួយគត់។

❖ ចូរប្រុងប្រយ័ត្ន! កុំជឿថាភ្លៀងធ្លាក់ដោយសារមកពីផ្កាយ ឬមកពីរដូវរបស់វា ពីព្រោះវាជាអំពើស្ទីរិក តាមពិតវាមកពី អល់ឡោះ។

❖ ចូរប្រុងប្រយ័ត្ន! កុំស្បថនឹងសត្វលោកក្រៅពី អល់ឡោះ ពីព្រោះវាជាអំពើស្ទីរិក។ ណាពីបានមានប្រសាសន៍ថា៖ មានន័យថា “**ជនណាស្បថនឹងអ្វីផ្សេងក្រៅពី អល់ឡោះ គឺជាអ្នកកាហ្វៀរឬស្ទីរិក**»។(អះម៉ាត់)

ដូចជាស្បថនឹងណាពី ឬស្បថនឹងសេចក្តីទុកចិត្ត ឬស្បថនឹងកេរ្តិ៍ឈ្មោះ ឬស្បថនឹងការធានារ៉ាប់រង ឬស្បថនឹងជីវិត។

❖ ចូរប្រុងប្រយ័ត្ន! កុំជេរប្រទេចពេលវេលា ជេរខ្យល់ ឬព្រះអាទិត្យ ឬអាកាសធាតុត្រជាក់ ឬអាកាសធាតុក្តៅ។ វាដូចជាការជេរប្រមាថ អល់ឡោះ។ ពីព្រោះ អល់ឡោះ ជាអ្នកបង្កើតវា។

❖ ចូរប្រុងប្រយ័ត្នចំពោះពាក្យ(បើសិន) បើសិនជាអ្នករងគ្រោះថ្នាក់រួច។ ពិតណាស់ ជាការបើកឱកាសឱ្យស្វៃតន។ មិនត្រឹមតែប៉ុណ្ណោះ ជាការប្រឆាំងនឹងការកំហិតកំណត់របស់ អល់ឡោះ។ ក៏ប៉ុន្តែ ចូរនិយាយថា អល់ឡោះ កំណត់តាមអ្វី



ដែលទ្រង់សព្វព្រះទ័យ។

❖ ចូរប្រុងប្រយ័ត្ន! កុំយកផ្នូរធ្វើជាម៉ាស្ជិត ពីព្រោះគេមិនសឡាតនៅក្នុងម៉ាស្ជិតដែលមានផ្នូរទេ។ អំពី អាអ៊ីស៊ះ បាននិយាយថា៖ ពិតណាស់រ៉សូលុលឡោះបានមានប្រសាសន៍នៅពេលគាត់ជិតស្លាប់ថា៖ មានន័យថា "**អល់ឡោះ បានដាក់បណ្តាសារពួកជ្វីហ្វនិងពួកគ្រិស្ទាន ដោយសារពួកគេបានយកផ្នូរណាពីរបស់ពួកគេធ្វើជាម៉ាស្ជិត គាត់ដាស់តឿនចំពោះអ្វីដែលពួកគេធ្វើ។**" អាអ៊ីស៊ះ បាននិយាយថា បើមិនដូច្នេះទេ ពួកគេច្បាស់លើកផ្នូរគាត់ឱ្យខ្ពស់ត្រដែត។ (អាល់ពូខរី)

រ៉សូលុលឡោះបានមានប្រសាសន៍ទៀតថា៖ មានន័យថា "**ពិតណាស់ (អ្នកជំនាន់មុន) ពួកអ្នកដែលពួកគេបានយកផ្នូររបស់ណាពីនិងផ្នូរកុសលបុគ្គលរបស់ពួកគេធ្វើជាម៉ាស្ជិត។ ចូរកុំយកផ្នូរធ្វើជាម៉ាស្ជិត ពិតណាស់ខ្ញុំបានហាមឃាត់ពួកអ្នកអំពីរឿងនោះ។**" (អាពូ អាវ៉ាណះ)

❖ អ្នកមិនត្រូវជឿចំពោះហាទីសដែលគេប្រឌិតចំពោះអ្នកនាំសារជំរុញឱ្យទទួចអង្វរសុំតាមរយៈហ្សាតរបស់ណាពី ឬតាមរយៈកុសលបុគ្គលនៃប្រជាជាតិរបស់គាត់។ វាគឺជាហាទីសដែលគេប្រឌិតឡើងមិនពិត។ មានដូចជា៖

មានន័យថា "**ចូរពួកអ្នកទទូចអង្វរសុំតាមរយៈបុណ្យស័ក្តិរបស់ខ្ញុំ ពីព្រោះបុណ្យស័ក្តិរបស់ខ្ញុំចំពោះ អល់ឡោះ ធំធេងណាស់។**"

មានន័យថា "**បើពួកអ្នកចង់ឱ្យខ្ញុំដឹងពីសុខទុក្ខពួកគេ ចូរសុំពីសាកសពក្នុងផ្នូរ។**"

មានន័យថា "**ពិតណាស់ អល់ឡោះ បានបញ្ជូនទេវតាជាភ្នាក់ងារទទួលខុសត្រូវលើគ្រប់ផ្នូរវ៉ាលីទាំងអស់ ដែលជួយសម្រេចបំណងរបស់មនុស្ស»។**

មានន័យថា "**បើសិនជានរណាម្នាក់ក្នុងចំណោមពួកអ្នកសង្ឃាល្អចំពោះដុំថ្ម គឺដុំថ្មនោះមានប្រយោជន៍សម្រាប់គេ។**" នៅមានច្រើនទៀត។

❖ ចូរប្រុងប្រយ័ត្ន! កុំប្រារព្ធពីធីបុណ្យដែលគេហៅថាបុណ្យបែបសាសនាដូចជាបុណ្យខួបកំណើតណាពី ថ្ងៃបុណ្យដំណើរឡើងលើមេឃរបស់ណាពី យប់ពាក់កណ្តាលខែហ្សាក់ហ្បាន និងពីធីបុណ្យផ្សេងៗទៀត ដែលជាការប្រឌិតថ្មីដោយគ្មានភស្តុតាងបញ្ជាក់ពីអ្នកនាំសារ គ្មានផងដែរពីសហាការីរបស់គាត់ ដែលពួកគាត់ស្រឡាញ់ណាពីខ្លាំងជាងយើង ហើយពួកគាត់យកចិត្តទុកដាក់ចំពោះអំពើល្អខ្លាំងជាងយើង។ បើសិនជាអំពើទាំងនេះជាអំពើល្អ ពួកគាត់ច្បាស់ជាធ្វើមុនពួកយើងទៅទៀត។





# ពាក្យសច្ចា( ឡា អ៊ីឡាហា អ៊ីល ឡល់ឡោះ )

ពាក្រពេច៍ទាំងអស់នេះគឺបានរួមបញ្ចូលទៅក្នុងវានូវគោលគ្រឹះពីរយ៉ាង។ទីមួយ: (لا إله) វាគឺបដិសេធភាពជាម្ចាស់ដ៏ពិតប្រាកដផ្សេងពីអល់ឡោះ។ទីពីរ: (إلا الله) វាគឺការទទួលស្គាល់ភាពជាម្ចាស់ដ៏ពិតប្រាកដសម្រាប់អល់ឡោះតែម្នាក់គត់។ អល់ឡោះបានមានបន្ទូលថា៖

﴿وَإِذۡ قَالَ إِبۡرَٰهِيمُ لِأَبِيهِ وَقَوۡمِهِۦٓ إِنَّنِي بَرَآءٞ مِّمَّا تَعۡبُدُونَ ٢٦ إِلَّا ٱلَّذِي فَطَرَنِي فَإِنَّهُۥ سَيَهۡدِينِ﴾ មានន័យថា៖ "ហើយ( ចូរចងចាំ )នៅពេលដែលអ៊ីព្រហ៊ីមបាននិយាយទៅ កាន់ឪពុក និងក្រុមរបស់គាត់ថា: ពិតប្រាកដណាស់ ខ្ញុំមិនពាក់ព័ន្ធ នឹងអ្វីដែលពួកអ្នកកំពុងគោរពសក្ការៈនោះឡើយ"។ (អាសហ្សុខរ៉ហ្វ : ២៦-២៧)

មិនគ្រប់គ្រាន់នោះទេបើគ្រាន់តែធ្វើការគោរពសក្ការៈទៅចំពោះអល់ឡោះនោះ តែចាំបាច់ត្រូវគោរពទៅចំពោះទ្រង់តែមួយនាក់គត់ ហើយការតៅហ៊ីទក៏មិនត្រឹមត្រូវដែរលើកលែងតែរួមបញ្ចូលរវាងការផ្តលភាពតែមួយទៅចំពោះអល់ឡោះ ដោយការតៅហ៊ីទ និងបោះបង់ចោលប្រការស៊ីរិក។

**មានរីវ៉ាយ៉ាត់ក្នុងហាទីសថាកូនសោឋានសួគ៌គឺឡាអ៊ីឡាហាអ៊ីលឡលឡោះ** «لا إله إلا الله» ។ ក៏ប៉ុន្តែ តើគ្រប់អ្នកដែលបានពោលវាអាចបើកឋានសួគ៌បានដែរឬទេ? មានគេសួរវ៉ាហាប់ ពិន មូណាប់ពិស ថា តើពាក្យឡាអ៊ីឡាហាអ៊ិលឡលឡោះមិនមែនជាកូនសោឋានសួគ៌ទេឬ? គាត់បានឆ្លើយថា បាទ ពិតណាស់វាជាកូនសោឋានសួគ៌។ ក៏ប៉ុន្តែសោនោះមានធ្មេញពីរ បើអ្នកមានសោដែលមានធ្មេញពីរ គេបើកឱ្យអ្នក តែបើអ្នកអត់មានទេគេអត់បើកឱ្យអ្នកទេ។

មានហាទិសណាពីជាច្រើនបានបកស្រាយប្រាប់ពីធ្មេញសោនេះ។ ដូចណាពីបានមានប្រសាសន៍ថា : «من قال: لا إله إلا الله مخلصًا...»، «مستيقنًا بها قلبه...»

មានន័យថា «បុគ្គលណាដែលបានពោលពាក្យ ឡាអ៊ីឡាហាអ៊ីលលល់ឡោះ ដោយចិត្តស្មោះស ជឿជាក់ និងពោលពាក្យពិតចេញពីដួងចិត្តរបស់គេ»។ល។ គេដាក់លក្ខខណ្ឌចូលឋានសួគ៌អាស្រ័យលើការយល់ដឹងពីអត្ថន័យនៃពាក្យនេះ។ មានជំហររឹងមាំលើពាក្យនេះរហូតដល់ស្លាប់ គោរពប្រណិប័តន៍តាមអត្ថន័យរបស់វា។ល។

**មានហាទីសជាច្រើនដែលពួកអ្នកប្រាជ្ញបានដកស្រង់អត្ថន័យរបស់វាជាលក្ខខណ្ឌដែលចាំបាច់ត្រូវតែមានគ្រប់លក្ខណៈ ដោយគ្មានឧបសគ្គ រហូតដល់ពាក្យឡាអ៊ីឡាហាអ៊ិលលល់ឡោះនេះក្លាយជាកូនសោសម្រាប់បើកឋានសួគ៌ ហើយមានប្រយោជន៍សម្រាប់អ្នកដែលពោលវា។**

**លក្ខខណ្ឌដែលជាធ្មេញសោមានដូចខាងក្រោម :**

**១.ចំណេះវិជ្ជា** ដោយហេតុថាគ្រប់ពាក្យទាំងអស់សុទ្ធតែមានន័យ។ ដូច្នេះចាំបាច់




ត្រូវតែដឹងពីអត្ថន័យនៃពាក្យ«ឡាអ៊ីឡាហាអិលលល់ឡោះ» ឱ្យច្បាស់លាស់។ បដិសេធការគោរពអ្នកដទៃក្រៅពីអល់ឡោះ ហើយត្រូវគោរពសក្ការៈចំពោះទ្រង់តែមួយគត់។ មានន័យថា គ្មានម្ចាស់ណាដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែអល់ឡោះ។ ទ្រង់បានមានព្រះបន្ទូលថា:﴿إِلَّا مَن شَهِدَ بِٱلۡحَقِّ وَهُمۡ يَعۡلَمُونَ﴾មានន័យថា: «លើកលែងតែអ្នកដែលបានធ្វើសាក្សីដោយសច្ចៈ ហើយពួកគេយល់ដឹង»។(អាសហ្ស៊ូខរ៍ហ្វ : ៨៦)

ណាពីបានមានប្រសាសន៍ថា : « مَنْ مَاتَ وَهُوَ يَعْلَمُ أَنَّهُ لا إِلَهَ إِلا الله دَخَلَ الْجَنَّةَ » មានន័យថា : «ជនណាបានស្លាប់ ហើយគេដឹងថាឡាអ៊ីឡាហាអិលលល់ឡោះ គឺគេបានចូលឋានសួគ៌»។(មូស្លីម)

២.ភាពជឿជាក់ គេត្រូវមានជំនឿជឿជាក់យ៉ាងដាច់ខាតចំពោះអត្ថន័យរបស់វា។ ពីព្រោះពាក្យនេះមិនទទួលយកការមន្ទិលសង្ស័យ និងភាពស្ទាក់ស្ទើរឡើយ។ តែត្រូវមានជំនឿជឿជាក់យ៉ាងដាច់ខាត។

**អល់ឡោះបានពិពណ៌នាពីអ្នកមានជំនឿថា :**

﴿إِنَّمَا ٱلۡمُؤۡمِنُونَ ٱلَّذِينَ ءَامَنُواْ بِٱللَّهِ وَرَسُولِهِۦ ثُمَّ لَمۡ يَرۡتَابُواْ وَجَٰهَدُواْ بِأَمۡوَٰلِهِمۡ وَأَنفُسِهِمۡ فِي سَبِيلِ ٱللَّهِۚ أُوْلَٰٓئِكَ هُمُ ٱلصَّٰدِقُونَ﴾

មានន័យថា : «ពិតណាស់ ពួកអ្នកមានជំនឿដែលជឿចំពោះអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ បន្ទាប់មកពួកគេមិនសង្ស័យ ហើយបានតស៊ូក្នុងផ្លូវអល់ឡោះដោយទ្រព្យសម្បត្តិរបស់ពួកគេ និងខ្លួនប្រាណរបស់ពួកគេ។ អ្នកទាំងនោះជាអ្នកដែលមានជំនឿយ៉ាងពិតប្រាកដ»។(អាល់ហ៊ូជូរ៉ត : ១៥)

ដូច្នេះការពោលដោយពាក្យសម្ដីវាមិនទាន់គ្រប់គ្រាន់ទេ តែត្រូវមានជំនឿយ៉ាងពិតប្រាកដនៅក្នុងចិត្ត ហើយប្រសិនបើមិនអាចធ្វើបានទេនោះគេគឺជាអ្នកមូណាហ្វិក(ពុតត្បុត)។ **ណាពីបានមានប្រសាសន៍ថា៖**

« أَشْهَدُ أَنْ لا إِلَه إِلا الله وَأَنِّي رَسُولُ الله لا يَلْقَى الله بِهِمَا عَبْدٌ غَيْرَ شَاكٍّ فِيهِمَا إِلا دَخَلَ الجَنَّةَ » មានន័យថា «ខ្ញុំធ្វើសាក្សីថាគ្មានទេម្ចាស់ដ៏ពិតប្រាកដគឺមានតែអល់ឡោះ ហើយខ្ញុំគឺជាអ្នកនាំសាររបស់អល់ឡោះ។ គ្មានខ្ញុំបម្រើរបស់អល់ឡោះណាម្នាក់បានជួបទ្រង់ដោយពោលវាទាំងពីរដោយគ្មានការសង្ស័យនោះ លើកលែងតែអ្នកនោះនឹងបានចូលឋានសួគ៌»។(មូស្លីម)

៣.ទទួលយក នៅពេលអ្នកយល់ដឹងពាក្យនេះ ហើយជឿជាក់រួច ចាំបាច់ត្រូវមានលទ្ធផលរបស់វា។ ដោយការទទួលយកនូវអ្វីដែលពាក្យនេះតម្រូវឱ្យមានដោយវាចា ចិត្ត។ ជនណាបដិសេធមិនទទួលស្គាល់តាវហេត គឺជាកាហ្វៀរ។ ទោះបីគេបដិសធដោយភាពក្រអឺតក្រទម ឬប្រឆាំងរឹងរូស ឬឈ្នានីស។ អល់ឡោះបានពិពណ៌នាពីពួកកាហ្វៀរដែលប្រឆាំងដោយភាពក្រអឺតក្រទមថា: ﴿إِنَّهُمۡ كَانُوٓاْ إِذَا قِيلَ لَهُمۡ لَآ إِلَٰهَ إِلَّا ٱللَّهُ يَسۡتَكۡبِرُونَ﴾ មានន័យថា «ពិតណាស់ កាលពីមុន នៅពេលគេនិយាយទៅកាន់ពួកគេថា គ្មានទេម្ចាស់





ផ្សេងត្រូវគោរពសក្ការៈពិតប្រាកដក្រៅពីទ្រង់ ពួកគេក្រអឺតក្រទម»។ (អាសហ្វហ្វាត:៣៥)

**៤.ប្រណិប័តន៍** សម្រាប់តាវហេតត្រូវប្រណិប័តន៍តាមទាំងស្រុង។ នេះជាខ្នាតដ៏ពិតប្រាកដ ហើយជាទិដ្ឋភាពជាក់ស្តែងនៃគោលជំនឿ។ ចំណុចនេះសម្រេចបានដោយការអនុវត្តតាមអ្វីដែលអល់ឡោះបានបង្គាប់ប្រើ និងបោះបង់ចោលនូវអ្វីដែលទ្រង់បានហាមឃាត់។ ទ្រង់បានមានព្រះបន្ទូលថា :

﴿وَمَن يُسۡلِمۡ وَجۡهَهُۥٓ إِلَى ٱللَّهِ وَهُوَ مُحۡسِنٞ فَقَدِ ٱسۡتَمۡسَكَ بِٱلۡعُرۡوَةِ ٱلۡوُثۡقَىٰۗ وَإِلَى ٱللَّهِ عَٰقِبَةُ ٱلۡأُمُورِ﴾ មានន័យថា «**អ្នកណាប្រគល់ខ្លួនចំពោះអល់ឡោះ ហើយគេជាអ្នកសាងកុសលធម៌។ ពិតណាស់ គេបានប្រកាន់ខ្ជាប់នឹងខ្សែដ៏រឹងមាំ(គម្ពីរអាល់គួរអាន) ហើយលទ្ធផលចុងក្រោយនៃកិច្ចការទាំងអស់នឹងវិលត្រលប់ទៅកាន់អល់ឡោះជាម្ចាស់**»។ (លុកម៉ាន : ២២) **នេះជាការប្រណិប័តន៍ទាំងស្រុង។**

**៥.ស្មោះត្រង់** ពោលពាក្យនេះដោយស្មោះត្រង់ គ្មានការកុហកភូតភរ។ ជនណាពោលតែលើអណ្តាត ហើយចិត្តរបស់គេបោកប្រាស់នោះ គឺជននោះជាមូណាហ្វិក(ពុតត្បុត)។ អល់ឡោះបានមានព្រះបន្ទូលស្តីបន្ទោសពួកមូណាហ្វិក(ពុតត្បុត) ថា : ﴿يَقُولُونَ بِأَلۡسِنَتِهِم مَّا لَيۡسَ فِي قُلُوبِهِمۡ﴾ មានន័យថា: «**ពួកគេនិយាយតែលើអណ្តាតរបស់ពួកគេប៉ុណ្ណោះ ពុំមែនជាអ្វីដែលនៅក្នុងដួងចិត្តរបស់ពួកគេនោះទេ**»។(អាល់ហ្វាតហ៍ : ១១)

**៦.ស្រលាញ់ចូលចិត្ត** អ្នកមានជំនឿត្រូវស្រលាញ់ពាក្យនេះ ហើយត្រូវអនុវត្តតាមអ្វីដែលពាក្យនេះទាមទារចង់បាន។ អ្នកដែលមានពាក្យនេះក្នុងខ្លួនត្រូវស្រលាញ់អ្នកដែលពោលពាក្យនេះ។ សញ្ញាសម្គាល់នៃបុគ្គលម្នាក់ស្រលាញ់អល់ឡោះគឺគេទុកការស្រលាញ់អល់ឡោះជាអាទិភាព ទោះបីវាផ្ទុយនឹងទំនើងចិត្តរបស់គេ។ ត្រូវស្រលាញ់គាំទ្រអ្នកដែលស្រលាញ់គាំទ្រអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់។ ម្យ៉ាងទៀត ត្រូវប្រឆាំងចំពោះអ្នកដែលប្រឆាំងនឹងអល់ឡោះ។ ប្រតិបត្តិតាមណាពីអនុវត្តតាមកេរដំណែលរបស់គាត់ ហើយទទួលយកការចង្អុលបង្ហាញរបស់គាត់។

**៧.សទ្ធាជ្រះថ្លា** ត្រូវពោលពាក្យនេះដោយដួងចិត្តជ្រះថ្លាចំពោះអល់ឡោះ។ អល់ឡោះបានមានព្រះបន្ទូលថា: ﴿وَمَآ أُمِرُوٓاْ إِلَّا لِيَعۡبُدُواْ ٱللَّهَ مُخۡلِصِينَ لَهُ ٱلدِّينَ حُنَفَآءَ﴾ មានន័យថា «**គេមិនបង្គាប់ឱ្យពួកគេគោរពសក្ការៈចំពោះអល់ឡោះលើកលែងតែពួកគេគោរពដោយចិត្តជ្រះថ្លា សម្រាប់ទ្រង់សាសនាដ៏ត្រឹមត្រូវ (ងាកចេញពីខុសទៅរកត្រូវ)**»។ (អាល់ហ្ពៃយីណះ: ៥) ណាពីបានមានប្រសាសន៍ថា:

«فَإِنَّ اللهَ قَدْ حَرَّمَ عَلَى النَّارِ مَنْ قَالَ لا إِلَهَ إِلا اللهُ يَبْتَغِي بِذَلِكَ وَجْهَ اللهِ» មានន័យថា «**ពិតប្រាកដណាស់អល់ឡោះបានហាមឃាត់ឋាននរកមិនឱ្យឆេះអ្នកដែលបានពោលពាក្យឡាអ៊ីឡាហាអ៊ិលល់ឡោះដោយចិត្តជ្រះថ្លាចំពោះអល់ឡោះ**»។ (អាល់ពូខរី) នេះជាលក្ខខណ្ឌរួម ចាំបាច់ត្រូវអនុវត្តតាមពាក្យនេះ និងរក្សាវាឱ្យឋិតថេររហូតដល់ស្លាប់។




## شهادة: أن محمدا رسول الله

សាកសពនៅក្នុងផ្នូរត្រូវបានគេសាកល្បង និងសួរបីសំនួរ បើគេឆ្លើយរួច គេនឹងបានរួចផុតពីទារុណកម្ម តែបើឆ្លើយមិនរួចត្រូវវិនាសខ្លួន។ សំនួរទាំងនោះមាន : នរណាជាណាពីរបស់អ្នក? គេមិនអាចឆ្លើយបានទេលើកលែងតែអ្នកដែលអល់ឡោះបានជួយឱ្យគេសម្រេចគ្រប់លក្ខខណ្ឌទាំងអស់នៅក្នុងលោកនេះ ទ្រង់ពង្រឹងស្មារតីរបស់គេ និងជំរុញចិត្តរបស់គេឱ្យចេះឆ្លើយខណៈដែលខ្លួនគេនៅក្នុងផ្នូរ។ ពាក្យនេះមានប្រយោជន៍ចំពោះគេនៅថ្ងៃដែលទ្រព្យសម្បត្តិនិងកូនចៅមិនអាចជួយជាប្រយោជន៍ដល់គេ។

**លក្ខខណ្ឌទាំងនោះមាន :**

១.ប្រតិបត្តិតាមនូវអ្វីដែលណាពីបង្គាប់ប្រើៈ ដោយអល់ឡោះបានបង្គាប់ឱ្យយើងប្រតិបត្តិតាមណាពី។ អល់ឡោះបានមានព្រះបន្ទូលថា : ﴿مَّن يُطِعِ ٱلرَّسُولَ فَقَدۡ أَطَاعَ ٱللَّهَ﴾ មានន័យថា «**នរណាប្រតិបត្តិតាមអ្នកនាំសារ( ណាពីមូហាំម៉ាត់ )គឺគេពិតជាប្រតិបត្តិតាមអល់ឡោះ**»។(អាន់នីសាក : ៨០)

អល់ឡោះបានមានបន្ទូលទៀតថា៖ ﴿قُلۡ إِن كُنتُمۡ تُحِبُّونَ ٱللَّهَ فَٱتَّبِعُونِي يُحۡبِبۡكُمُ ٱللَّهُ﴾ មានន័យថា៖ **ចូរអ្នកពោលថាៈប្រសិនបើពួកអ្នកស្រឡាញ់អល់ឡោះ ចូរពួកអ្នកប្រតិបត្តិតាមខ្ញុំ អល់ឡោះពិតជាស្រឡាញ់ពួកអ្នក។** (អាលីអ៊ីមរ៉ន : ៣១)

ការចូលឋានសួគ៌គឺអាស្រ័យលើការប្រតិបត្តិចំពោះណាពី។ ណាពីបានមានប្រសាសន៍ថា :

« كُلُّ أُمَّتِي يَدْخُلُونَ الْجَنَّةَ إِلا مَنْ أَبَى. قَالُوا: يَا رَسُولَ اللهِ: وَمَنْ يَأْبَى؟ قَالَ: مَنْ أَطَاعَنِي دَخَلَ الْجَنَّةَ وَمَنْ عَصَانِي فَقَدْ أَبَى »

មានន័យថា«**ប្រជាជាតិរបស់ខ្ញុំទាំងអស់នឹងចូលឋានសួគ៌ លើកលែងតែអ្នកដែលប្រកែក។ ពួកគេបានសួរថា បពិត្រអ្នកនាំសារអល់ឡោះ នរណាជាអ្នកប្រកែក? គាត់បានឆ្លើយថា អ្នកណាប្រតិបត្តិតាមខ្ញុំ អ្នកនោះចូលឋានសួគ៌ ហើយអ្នកណាប្រឆាំងនឹងខ្ញុំ អ្នកនោះប្រកែក**»។ (អាល់ពូខរី)

នរណាស្រលាញ់ណាពី ចាំបាច់ប្រតិបត្តិតាមគាត់។ ពីព្រោះការប្រតិបត្តិតាមគាត់ជាផ្លែផ្កានៃការស្រលាញ់គាត់។ នរណាគិតថាការស្រលាញ់ណាពី មិនចាំបាច់ប្រតិបត្តិតាមនោះគឺជាអ្នកដែលនិយាយភូតកុហក។

**២.ជឿនូវអ្វីដែលគាត់ប្រាប់ :** ជនណាបដិសេធអ្វីដែលត្រឹមត្រូវអំពីណាពី ដោយសារទំនើងចិត្ត និងកិលេសតណ្ហា អ្នកនោះបដិសេធចំពោះអល់ឡោះនិងអ្នកនាំសាររបស់ទ្រង់។ ពីព្រោះណាពីគ្មានកំហុស ហើយមិននិយាយកុហក។ អល់

ទ្បោះបានមានព្រះបន្ទូលថា : ﴿وَمَا يَنطِقُ عَنِ ٱلۡهَوَىٰٓ﴾ មានន័យថា «**គេ(ណាពី)មិនបាននិយាយតាមទំនើងចិត្តនោះទេ**»។ (អាន់ណាជម៍ : ៣)

**៣.ជៀសវាងពីអ្វីដែលគាត់បានហាមឃាត់ :** ផ្តើមដោយអំពើបាបកម្រិតធ្ងន់បំផុតគឺអំពើស្ហ៊ីរិក បន្ទាប់មកអំពើបាបកម្រិតធ្ងន់បន្ទាប់ និងអំពើដែលនាំឱ្យវិនាស ហើយបញ្ចប់ដោយអំពើបាបកម្រិតស្រាល និងប្រការមិនគប្បីគឺមឹករ៉ូស។ កម្រិតនៃជំនឿរបស់បុគ្គលម្នាក់កើនឡើងតាមកម្រិតនៃការស្រលាញ់របស់គេចំពោះណាពី។ បើកាលណាជំនឿរបស់គេកើនឡើង គឺអល់ទ្បោះធ្វើឱ្យគេពេញចិត្តនឹងអំពើកុសលត្រឹមត្រូវ ហើយស្អប់ខ្ពើមអំពើគួហ្វរ អំពើអបាយមុខ និងអំពើអាក្រក់ទាំងឡាយ។

**៤.មិនត្រូវគោរពអល់ទ្បោះលើកលែងតែតាមអ្វីដែលទ្រង់បានបង្គាប់ប្រើតាមរយៈណាពីរបស់ទ្រង់ :** ជាគោលការណ៍នៃការគោរពសក្ការៈ(អ៊ីហ្បាហ្ទះ)គឺគេហាម។ ដូច្នេះ ពុំត្រូវគោរពសក្ការៈចំពោះអល់ទ្បោះលើកលែងតែតាមអ្វីដែលណាពីបាននាំមក។ ណាពីគាត់បានមានប្រសាសន៍ថា៖ «مَنْ عَمِلَ عَمَلاً لَيْسَ عَلَيْهِ أَمْرُنَا فَهُوَ رَدٌّ» មានន័យថា «**នរណាធ្វើអាម៉ាល់(ការប្រតិបត្តិ) អ្វីមួយពុំមែនជាការបង្គាប់ប្រើរបស់យើងគឺត្រូវគេច្រានចោល**»។(មូស្លីម)

មានន័យថា គេច្រានចោលមិនទទួលស្គាល់។

**សារប្រយោជន៍** ចូរជ្រាបចុះ ការស្រលាញ់ណាពី និងស្រលាញ់នូវអ្វីដែលគាត់នាំមកជាកាព្វកិច្ច។ ចំពោះអ្នកដែលស្អប់ខ្ពើមអ្វីមួយដែលអ្នកនាំសារបាននាំមក បើទោះជាគេអនុវត្តវាក៏ដោយ គឺគេក្លាយជាកាហ្វៀរ។ មិនត្រឹមតែស្រលាញ់ប៉ុណ្ណោះទេ ចាំបាច់ត្រូវស្រលាញ់គាត់ជាងអ្វីៗទាំងអស់ រហូតដល់ខ្លួនឯងក៏មិនត្រូវស្រលាញ់ជាងគាត់ និងជាងអ្វីដែលគាត់បាននាំមកនោះដែរ។ ពិតណាស់ បុគ្គលម្នាក់ បើសិនជាគេស្រលាញ់អ្វីមួយគឺគេឱ្យតម្លៃវា និងឱ្យតម្លៃអ្វីដែលស្របតាមវា។ អ្នកដែលស្មោះត្រង់ក្នុងការស្រលាញ់ណាពីគឺអ្នកដែលមានសញ្ញាសម្គាល់ដូចជាការយកគំរូតាមគាត់ ប្រតិបត្តិតាមស៊ុណ្ណះរបស់គាត់ទាំងកាយ និងវាចា។ ប្រតិបត្តិតាមបទបញ្ជារបស់គាត់ ជៀសវាងពីបំរាមរបស់គាត់។ ប្រកាន់យកក្រមសីលធម៌របស់គាត់ទាំងពេលពិបាក និងពេលស្រណុក ពេលឧស្សាហ៍ និងពេលខ្ជិលច្រអូស។ ការប្រតិបត្តិ និងការស្តាប់បង្គាប់តាមគឺជាផ្លែផ្កានៃសេចក្តីស្រលាញ់។ គ្មានពីរប្រការនេះ ក៏គ្មានសេចក្តីស្រលាញ់ដែរ។ សម្រាប់ការស្រលាញ់ណាពីមានសញ្ញាសម្គាល់ច្រើនដូចជា រំឭកចំពោះគាត់ និងសឡាវ៉ាតចំពោះគាត់ឱ្យបានច្រើន។ បុគ្គលណាស្រលាញ់អ្វីមួយគឺគេរំឭកអ្វីនោះច្រើនជាងគេ។ ក្នុងនោះមានដូចជា ការនឹកចង់ជួបគាត់។ គ្រប់មិត្តសម្លាញ់ទាំងអស់តែងតែនឹងនាដល់មិត្តសម្លាញ់របស់ខ្លួន។ ម្យ៉ាងទៀតត្រូវលើកតម្កើងគាត់នៅពេលរំឭកឈ្មោះរបស់គាត់។ សៀខ អ៊ិស្ហាក បាននិយាយថា "សហ



ការីរបស់ណាពីដែលនៅរស់ក្រោយគាត់ កាលណាពួកគេរំឭកឈ្មោះរបស់គាត់គឺពួកគេភ័យឡើងញ័រខ្លួន ហើយពួកគេយំ។ លើសពីនេះ ស្អប់អ្នកដែលស្អប់គាត់ ចងសត្រូវ និងបោះបង់អ្នកដែលប្រព្រឹត្តផ្ទុយនឹងស៊ុណ្ណះ និងប្រឌិតថ្មីក្នុងសាសនារបស់គាត់ ដោយពួកអ្នកប្រព្រឹត្តអំពើប្រឌិតថ្មី និងពួកមូណាហ្វិក(ពុតត្បុត)។ ប្រការផ្សេងទៀតដូចជា ស្រលាញ់អ្នកដែលណាពីស្រលាញ់នៃក្រុមគ្រួសារគាត់ ភរិយាៗរបស់គាត់ និងសហការីរបស់គាត់នៃពួកមូហាជីរីន និងពួកអាន់ស្វើរ។ ប្រឆាំងចំពោះអ្នកដែលប្រឆាំងជំទាស់នឹងពួកគាត់ ហើយស្អប់ពួកអ្នកដែលស្អប់ ឬជេរប្រមាថពួកគាត់។ ប្រការមួយទៀតគឺ យកគំរូតាមអាកប្បកិរិយាដ៏ប្រពៃរបស់គាត់។ ព្រោះគាត់ជាមនុស្សដែលមានអាកប្បកិរិយាដ៏ប្រពៃជាងគេ រហូតដល់អាអ៊ីស្ហះប្រពន្ធគាត់បាននិយាយថា អាកប្បកិរិយារបស់អ្នកនាំសារអល់ឡោះគឺអាល់គួរអាន។ គាត់តម្រូវឱ្យខ្លួនគាត់ត្រូវតែធ្វើតាមអ្វីដែលគម្ពីរអាល់គួរអានបង្គាប់ប្រើ។

**រីឯចរិតលក្ខណៈរបស់ណាពីគឺ** គាត់ជាមនុស្សដែលក្លាហានជាងគេជាពិសេសនៅពេលធ្វើសង្គ្រាម។ គាត់ជាមនុស្សដែលមានចិត្តមេត្តាករុណាជាងគេ និងចិត្តទូលាយជាងគេជាពិសេសនៅក្នុងខែរ៉ម៉ាឌន។ គាត់ជាមនុស្សដែលម៉ត់ចត់ជាងគេបំផុតចំពោះបទបញ្ញារបស់អល់ឡោះ។ គាត់ជាមនុស្សម្នាក់ដែលទូន្មានប្រៀនប្រដៅមនុស្សខ្លាំងជាងគេ។ គាត់ជាមនុស្សដែលអត់ធ្មត់ខ្លាំងជាងគេ។ គាត់មិនដែលសងសឹកដើម្បីខ្លួនឯង។ គាត់ជាមនុស្សដែលឱនលំទោនខ្លាំងជាងគេ។ គាត់ខ្មាសអៀនជាងស្ត្រីក្រមុំដែលនៅក្នុងផ្ទះ។ គាត់ធ្វើល្អជាមួយគ្រួសារខ្លាំងជាងគេ។ គាត់អាណិតស្រលាញ់ចំពោះសត្វលោកខ្លាំងជាងគេ។ល។




# ការសម្អាត

សទ្បាតគឺជារូកុនទីពីរនៃរូកុនឥស្លាម ហើយសទ្បាតមិនអាចត្រឹមត្រូវបានទេលើកលែង តែមានភាពជ្រះស្អាត ហើយភាពជ្រះស្អាតអាចកើតឡើងទៅបានតាមរយៈទឹក ឬធូលី។

ប្រភេទទឹក ១. ទឹកជ្រះស្អាត គឺជាតុដើមវាស្អាត និងអាចសម្អាតអ្វីផ្សេងទៀតបាន។ គឺអាចសម្អាតហាទីសនិងរបស់កខ្វក់។

២. ណាជិស : ជាអ្វីដែលប្រឡាក់ឬលាយភាពកខ្វក់ បើសិនជាតិចតួច។ ឬប្រែប្រួលរសជាតិរបស់វា ឬពណ៌របស់វា ឬក្លិនរបស់វាបើសិនជាច្រើន។

កំណត់សម្គាល់:ទឹកច្រើនមិនអាចក្លាយជាកខ្វក់ លុះត្រាតែវាប្រែប្រួលលក្ខណៈណាមួយរបស់វាគឺ ពណ៌ រសជាតិ និងក្លិន។ ទឹកតិចក្លាយជាកខ្វក់ដោយការធ្លាក់របស់កខ្វក់ទៅក្នុងវា។ គេចាត់ទុកទឹកច្រើន នៅពេលណាទឹកនោះមានចំណុះលើសពីពីរគូឡះ(ប្រហែលជា២១០លីត)។

ភាជន៍: គ្រប់ភាជន៍ដែលស្អាតទាំងអស់គេអនុញ្ញាតឱ្យប្រើប្រាស់បានលើកលែងតែភាជន៍ដែលធ្វើពីមាស និងប្រាក់។ ការសម្អាតដោយប្រើប្រាស់របស់ទាំងពីរនេះគឺត្រឹមត្រូវតែមានបាប។ គេអនុញ្ញាតឱ្យប្រើប្រាស់ភាជន៍ និងសម្លៀកបំពាក់របស់ពួកកាហ្វៀរ លើកលែងតែដឹងថាវាប្រឡាក់របស់កខ្វក់។

ស្បែកខ្មោចសត្វ : វាណាជិសដាច់ខាត ខ្មោចសត្វមានពីរប្រភេទ :

១. ស្បែកសត្វដែលគេមិនហូបសាច់។ ២.ស្បែកសត្វគេហូបសាច់តែគេមិនបានសម្លេះ។ ស្បែកសត្វដែលគេបរិភោគសាច់តែគេមិនបានសម្លេះ។ បើគេយកស្បែកវាទៅសម្លាប់ គឺគេអនុញ្ញាតឱ្យប្រើប្រាស់បាននៅពេលវាស្ងួត មិនមែននៅស្រស់ទេ។

**លាងជម្រះគឺ** សម្អាតអ្វីដែលចេញពីផ្លូវមុខនិងផ្លូវក្រោយ។ បើសម្អាតនឹងទឹកហៅថា លាង។ តែបើសម្អាតនឹងដុំថ្មឬក្រដាស់ឬអ្វីផ្សេងពីនោះគេហៅថា កិត។ លក្ខខណ្ឌដែលគេអនុញ្ញាតឱ្យកិតមានមួយគឺត្រូវសម្អាតនឹងរបស់ដែលស្អាត របស់ដែលគេមិនហូប។ ត្រូវប្រើប្រាស់ដុំថ្មឱ្យលើសពីចំនួនបីដុំ។ ការលាងនិងកិតចាំបាច់ចំពោះអ្នកដែលបន្ទោបង់។ ហាមអ្នកបន្ទោបង់ អង្គុយនៅកន្លែងនោះយូរលើសពីតម្រូវការ។ ហាមបន្ទោបង់ក្នុងទឹកនឹង ឬតាមផ្លូវគេដើរ ឬក្រោមម្លប់ ឬក្រោមដើមឈើដែលមានផ្លែ និងនៅកណ្តាលវាលបែរមុខ ឬបែរខ្នងដាក់គិបទ្បាត់។

**មឹករ៉ូសចំពោះអ្នកដែលបន្ទោបង់ :**

យករបស់ដែលមានរំឭកឈ្មោះអល់ទ្បោះចូលបង្គន់ និយាយគ្នាពេលកំពុងបត់ជើងនោមដាក់រន្ធឬក្រហែងដី និងប្រការផ្សេងៗទៀត កាន់ប្រដាប់ភេទដោយដៃស្តាំ បែរមុខទៅគិបទ្បាត់នៅក្នុងបង្គន់ ហើយគេអនុញ្ញាតបើសិនជាមានការចាំបាច់។

សូណាត់សម្រាប់អ្នកដែលបន្ទោបង់: លាងសម្អាតឬកិតដោយចំនួនសេស។ អាចលាងសម្អាតជាមួយទឹកផងនិងដុំថ្មផងរួមគ្នា។



**ស៊ីវ៉ាក (ដុសធ្មេញ):** សូណាត់ឱ្យដុសធ្មេញដោយប្រើឈើទន់ដូចជាឈើអារ៉ាក(ស៊ូគី) ហើយសូណាត់មូអឹកកាត់ នៅពេលសឡាត សូត្រគួរអាន មុនយកទឹកវូហ្វ ក្រោកពីដំណេក ចូលម៉ាស្ជិត និងផ្ទះ និងនៅពេលធុំក្លិនមាត់។ល។ សូណាត់ឱ្យប្រើដៃស្ដាំដុសស៊ីវ៉ាក និងកាន់របស់ស្អាត ហើយប្រើដៃឆ្វេងសម្អាតអ្វីដែលមិនល្អ ឬមិនស្អាត។

**វូហ្វុ:** **១. លាងមុខ** នៅក្នុងនោះមានខ្ពុរមាត់ និងបញ្ចូលទឹកក្នុងច្រមុះហើយញើសចេញមកវិញ។ **២.លាងដៃ** ចាប់ពីចុងម្រាមដៃរហូតដល់កែងដៃទាំងពីរ។ **៣.**ជូតក្បាលជាមួយនឹងត្រចៀកទាំងពីរ។ **៤.**លាងជើងទាំងពីររហូតដល់ភ្នែកគោលទាំងពីរ ។ **៥.**លំដាប់លំដោយ ។ **៧.** បន្តបន្ទាប់។

**សូណាត់របស់វា:** ដុសធ្មេញ លាងដៃទាំងពីរជាមុន ខ្ពុរមាត់និងដាក់ទឹកចូលក្នុងច្រមុះមុននឹងញើសចេញមកវិញមុន លាងមុខ។ ចំពោះអ្នកដែលមិនបួស អាចខ្ពុរម៉ាត់និងបញ្ចូលទឹកក្នុងច្រមុះឱ្យដល់ទីជម្រៅ ហើយញើសចេញមកវិញ។ ញីពុកចង្កា និងឃ្លីម្រាមដៃ។ ចាប់ផ្ដើមពីអវៈយវៈខាងស្ដាំង លាងអវៈយវៈចំនួនពីរទៅបីដង ស្រូបទឹកចូលច្រមុះដោយដៃស្ដាំនិងញើសចេញមកវិញដោយដៃឆ្វេង ជូតអវៈយវៈ យកទឹកវូហ្វុឱ្យបានល្អ បន្ទាប់មកទូអាន់ូវអ្វីដែលមាននិទាននៅក្នុងហាទីសដែលត្រឹមត្រូវ។

**កាតព្វកិច្ចនៅពេលយកវូហ្វុ:** ចាប់ផ្ដើមដោយសូត្រ (بسم الله) អ្នកដែលក្រោកពីដេកនៅពេលយប់ត្រូវលាងដៃចំនួនបីដងមុននឹងលូកដៃទាំងពីរទៅក្នុងទឹក។

**ប្រការមឹករ៉ូស:** យកវូហ្វុកនឹងទឹកត្រជាក់ ឬក្ដៅ ។ លាងអវៈយវៈមួយលើសពីបីដង គ្រលាស់ទឹកចេញពីអវៈយវៈ លាងក្នុងភ្នែក។ រីឯការជូតទឹកបន្ទាប់ពីយកវូហ្វុរួចគឺគេអនុញ្ញាត។

**កំណត់សម្គាល់:** ខ្ពុរម៉ាត់ត្រូវបៀមទឹកអង្រង់លាងមាត់ ហើយបញ្ចូលទឹកក្នុងច្រមុះត្រូវបញ្ចូលឱ្យដល់ចំនុចដង្ហើម មិនមែនត្រឹមតែលូកដៃចូលប៉ុណ្ណោះទេ ហើយការញើសចេញមកវិញក៏ដូចគ្នាដែរ។ ប្រការទាំងពីរមិនត្រឹមត្រូវទេលើកលែងតែធ្វើតាមរបៀបនេះទើបត្រឹមត្រូវ។

**របៀបយកវូហ្វុ :** គឺនៀតនៅក្នុងចិត្ត បន្ទាប់មកសូត្រ (بسم الله)ពិសមិលឡះ និងលាងដៃទាំងពីររបស់គេ។ បន្ទាប់មកខ្ពុរមាត់និងបញ្ចូលទឹកក្នុងច្រមុះ ហើយញើសចេញមកវិញ និងលាងមុខ(ខ្នាតរបស់វាគឺចាប់ពីជើងសក់លើចិញ្ចើមរហូតដល់ពុកចង្កានិងចាប់ពីត្រចៀកម្ខាងទៅត្រចៀកម្ខាងទៀត)។ បន្ទាប់មកលាងដៃទាំងពីរជាមួយនឹងកំភួនដៃរហូតដល់កែងដៃទាំងពីរ។ បន្ទាប់មកជូតឱ្យសព្វក្បាលចាប់ពីជើងសក់ខាងមុខរហូតដល់កញ្ចឹងកនិងចន្លោះនៃត្រចៀកទាំងពីរព្រមជាមួយ




នឹងបញ្ចូលម្រាមដៃទាំងពីរទៅក្នុងរន្ធត្រចៀកទាំងពីរ និងយកមេដៃទាំងពីរជូតលើត្រចៀកទាំងពីរ។ បន្ទាប់មកលាងជើងរហូតដល់ភ្នែកគោលទាំងពីរ។

**កំណត់សម្គាល់:** បើពុកចង្កាស្តើងត្រូវលាងជ្រាបដល់ស្បែក តែបើក្រាស់វិញលាងត្រឹមតែលើពុកចង្កាជាការស្រេច។

**ជូតលើស្បែកជើងឃ្លុបៈ** គឺស្បែកជើងធ្វើពីស្បែក។ល។ តែបើសិនធ្វើពីកប្បាសគេហៅថាស្រោមជើង។ គេអនុញ្ញាតឱ្យជូតលើរបស់ទាំងពីរសម្រាប់ហាទីសតូចតែប៉ុណ្ណោះ។ គេអនុញ្ញាតឱ្យជូតលើវាដោយមានលក្ខខណ្ឌដូចតទៅ :

១\ត្រូវស្អាតនៅពេលពាក់ស្បែកជើង(បន្ទាប់ពីលាងជើងទី២របស់គេ)
២\ការសម្អាតដោយប្រើទឹក។ ៣\គ្រប់ជិតជើងទាំងពីរ ព្រោះជាកន្លែងហ្វ័រទូ។
៤\ជារបស់ដែលស្របច្បាប់ ៥\ មិនប្រឡាក់ភាពកខ្វក់។

**សាល់(ឈ្នួតក្បាល): គេអនុញ្ញាតឱ្យជូតពីលើសាល់ដោយមានលក្ខខណ្ឌដូចតទៅ :**
១\ជាបុរស ២\ **សាល់នេះ**ជួតជាប់លើក្បាលជាប្រចាំ ៣\ជូតសម្អាតសម្រាប់តែហាទីសតូចតែប៉ុណ្ណោះ ៤\ត្រូវសម្អាតដោយទឹក។

**ជូតលើកន្សែងទទូរក្បាល: គេអនុញ្ញាតឱ្យជូតលើវាបានដោយមានលក្ខខណ្ឌដូចតទៅ :** ១\ជាស្ត្រី២\ ទទូរពីក្រោមបំពង់ក ៣\ជូតសម្អាតសម្រាប់តែហាទីសតូចប៉ុណ្ណោះ ៤\ត្រូវសម្អាតដោយទឹក។ ៥\ទទូរវាជាប្រចាំ។

**រយៈពេលនៃការជូត: មួយថ្ងៃមួយយប់សម្រាប់អ្នកដែលនៅក្នុងភូមិ។ សម្រាប់អ្នកធ្វើដំណើរក្នុងរយៈចម្ងាយសឡាតកសើរ(៨៥គ.ម៉.)រយៈពេលបីថ្ងៃបីយប់។**

**ចាប់ផ្តើមជូត:** ចាប់ផ្តើមជូតបន្ទាប់ពីសម្អាតហាទីសរួច បន្ទាប់ពីពាក់វាទាំងពីររួចរាល់ រហូតដល់ម៉ោងដដែលនៅថ្ងៃស្អែកសម្រាប់អ្នកដែលនៅក្នុងភូមិ(២៤ម៉ោង)។

**ខ្នាតនៃការជូតស្បែកជើងឃ្លុប :** ជូតច្រើនបំផុតគឺពីចុងម្រាមជើងដល់កំភួនជើង ជូតនឹងម្រាមដៃ ហើយបើកម្រាមដៃ។

**កំណត់សម្គាល់:** ជនណាបានជូតនៅពេលកំពុងធ្វើដំណើរក្រោយមកគេត្រលប់វិលមកស្រុកកំណើតវិញ ឬនៅក្នុងភូមិបន្ទាប់មកគេក៏ធ្វើដំណើរ ឬមានភាពសង្ស័យពីពេលចាប់ផ្តើមជូត ដូច្នោះ គេជូតដូចអ្នកនៅក្នុងភូមិដែរ។

**ព្រួលរណបឆ្អឹង :** ជាបន្ទះឬស្សីគេប្រើសម្រាប់ឱបទប់ឆ្អឹងបាក់។ល។
គេអនុញ្ញាតឱ្យជូតដោយមានលក្ខខណ្ឌដូចតទៅ :
១\ត្រូវការប្រើប្រាស់វាជាចាំបាច់ ២\មិនត្រូវឱ្យលើសពីកន្លែងដែលចាំបាច់
៣\ត្រូវភ្ជាប់គ្នារវាងកន្លែងត្រូវជូតនិងអវៈយវៈផ្សេងទៀតដែលយកទឹកវូហ្ទុ។
បើសិនជាព្រួលរណបឆ្អឹងនោះលើសពីតម្រូវការចាំបាច់គឺត្រូវបកចេញ។ តែបើសិនខ្លាចមានគ្រោះថ្នាក់គេអនុញ្ញាតឱ្យជូតលើវា។



**អត្ថប្រយោជន៍ :** *ល្អវាត្រូវជូតលើស្បែកជើងឃ្លបនោះឱ្យស្មើគ្នាដោយមិនចាំបាច់ចាប់ផ្ដើមពីខាងស្ដាំមុនទេ។ * គេមិនអនុញ្ញាតឱ្យជូតបាតស្បែកជើងឃ្លបឬពីក្រោយវា ហើយគេមិនចាត់ទុកជាការត្រឹមត្រូវទេ បើគេជូតនៅត្រង់កន្លែងទាំងពីរនោះ។ *មិនគប្បីលាងស្បែកជើងឃ្លបជំនួសការជូតនិងការជូតច្រើនដង។ *សាល់និងក្រមាត្រូវជូតឱ្យបានច្រើនដង។

**ប្រការដែលនាំឱ្យខូចទឹកវូហ្វ :** ១\អ្វីដែលចេញពីផ្លូវទឹកនោម និងលាមក តែស្អាតគឺផោមនិងទឹកកាម។ ឬណាជីសដូចជាទឹកនោម និងទឹកម៉ាហ្សី( ទឹករំអិល)។
២\បាត់បង់ស្មារតីដោយការដេកលក់ ឬសន្លប់ លើកលែងតែដេកអង្គុយបន្តិចបន្តួច ឬដេកឈរគឺមិនធ្វើឱ្យខូចទឹកវូហ្វទេ។
៣\លេចអាចម៍ ឬលេចនោមតាមផ្លូវផ្សេងពីផ្លូវទាំងពីរ។
៤\ចេញអ្វីផ្សេងដែលណាជីស( ក្រៅពីទឹកនោមនិងលាមក )ពីខ្លួនប្រាណរបស់គេដូចជាឈាមហូរច្រើន។ ៥\ញ៉ាំសាច់អូដ្ឋ ៦\ប៉ះប្រដាប់ភេទដោយដៃទទេ ៧\ស្ត្រីនិងបុរសប៉ះគ្នាដោយចំណង់តណ្ហាគ្មានអ្វីទ្រាប់ ៨\ចេញពីសាសនាឥស្លាម។ ចំពោះអ្នកដែលជឿជាក់ថាគេមានវូហ្វ ហើយគេមានការសង្ស័យថាមានហាទីស ឬផ្ទុយពីនោះ គឺត្រូវកំណត់យកអ្វីដែលខ្លួនជឿជាក់។

**ការមុជទឹក : កត្តាចាំបាច់នៃការមុជទឹក** ១\ចេញទឹកកាមដោយការរួមដំណេក ឬដោយការយល់សប្ដិស្រួលអារម្មណ៍ ឬមិនស្រួលអារម្មណ៍។
២\បញ្ចូលអង្គជាតិទៅក្នុងយោនីស្ត្រីទោះមិនចេញទឹកកាមក៏ដោយ។
៣\អ្នកកាហ្វៀរចូលឥស្លាម ទោះបីគេធ្លាប់ចេញពីឥស្លាមក៏ដោយ។
៤\ ឈាមរដូវ ។ ៥\ឈាមឆ្លងទន្លេ។ ៦\សាកសពអ្នកមូស្លីម។

**កាតព្វកិច្ចមុជទឹក:** គ្រាន់តែស្រោចទឹកឱ្យសព្វពេញប្រាណដោយនៀតមុជទឹកជាការស្រេច។ ដាក់ទឹកចូលក្នុងមាត់ និងច្រមុះ ហើយញើសចេញមកវិញ។

**រីឯការមុជទឹកដែលពេញលក្ខណៈមានប្រាំបួនប្រការដូចតទៅ :** ១\នៀត ២\សូត្រ (بسم الله)ពិសមិលឡះ ៣\លាងដៃទាំងពីរមុននឹងលូកចូលទៅក្នុងការទឹក ៤\លាងប្រដាប់ភេទនិងអ្វីដែលប្រលាក់វា។ ៥\យកទឹកវូហ្វ ៦\ស្រោចទឹកលើក្បាលចំនួនបីដង ៧\មុជទឹកឱ្យសព្វរាងកាយ ៨\ជុសខ្លួនឱ្យសព្វ ៩\ចាប់ផ្ដើមពីខាងស្ដាំង។

**បំរាមចំពោះអ្នកដែលមានហាទីសតូច:** ១\ប៉ះគួរអាន ២\សឡាត ៣\តវ៉ាហ្វ។

**បំរាមចំពោះអ្នកដែលមានហាទីសធំបូកបន្ថែមជាមួយបីប្រការខាងលើមាន :**
១\សូត្រគួរអាន ២\នៅក្នុងម៉ាស្ជិតដោយគ្មានទឹកវូហ្វ។ មិនគួរសដេកទាំងមានជូណុប ដោយគ្មានទឹកវូហ្វ ហើយខ្ជះខ្ជាយក្នុងការប្រើប្រាស់ទឹក។

**តាយ៉ាំមុំ លក្ខខណ្ឌរបស់វាមាន :**

១\មិនអាចប្រើទឹកបាន ២\ដីស្អាត ស្របច្បាប់ ជាធូលី មិនមែនជាដីផុត។

**រូកុនរបស់វាមាន:**

១\ជូតមុខ បន្ទាប់មកជូតដៃរហូតដល់កដៃ បន្តបន្ទាប់និងលំដាប់លំដោយ។

**ប្រការដែលធ្វើឱ្យខូចតាយ៉ាំមុំ :** ១\ដូចប្រការដែលធ្វើឱ្យខូចវូហ្ទដែរ។ ២\មានទឹក បើសិនជាការតាយ៉ាំមុំនោះដោយសារគ្មានទឹក។ ៣\អស់ករណីលើកលែងដូចជាអ្នកតាយ៉ាំមុំដោយសារជំងឺ បន្ទាប់មកគេជាពីជម្ងឺវិញ។

**សូណាត់របស់វា៖** ១\ត្រូវមានលំដាប់លំដោយសម្រាប់អ្នកតាយ៉ាំមុំដែលមានហាទីសធំ។ ២\ពន្យារពេលរហូតដល់ម៉ោងសឡាតចុងក្រោយ។ ៣\សូត្រហ្សីកៀរទឹកវូហ្ទបន្ទាប់ពីតាយ៉ាំមុំរួច។

**ប្រការដែលមឹករ៉ូស :** ទះដៃលើដីដដែលៗច្រើនដង។

**របៀបតាយ៉ាំមុំ :** ត្រូវនៀត បន្ទាប់មកសូត្រ( بسم الله )ពិសមីលឡះ បន្ទាប់មកទៀតយកដៃទាំងពីរវាយដីចំនួនមួយដងគត់។ រួចយកមកជូតមុខនឹងបាតដៃរហូតដល់ចង្ការរបស់គេ។ បន្ទាប់មកទៀតជូតដៃ យកបាតដៃឆ្វេងជូតលើខ្នងដៃស្តាំ និងបាតដៃស្តាំជូតលើខ្នងដៃឆ្វេង។

**បំបាត់ណាជិស :** ណាជិសមានពីរប្រភេទ

១.ណាជីសធាតុ គឺជាណាជិសដែលមិនអាចសម្អាតបានដូចជា សត្វជ្រូក។ បើទោះជាយើងលាងសម្អាតវាយ៉ាងណាគឺវាមិនជ្រះស្អាតជាដាច់ខាត។

២.ណាជិសផ្នែកហូកុម គឺណាជិប្រឡាក់កន្លែងដែលជាតិកំណើតវាស្អាតដូចជា អាវ ដី ដូចមានចែងក្នុងតារាងខាងក្រោម

| ធាតុ | ច្បាប់ឬហូកុមវា | |
|---|---|---|
| សត្វ | ណាជិស | ឆ្កែ ជ្រូក និងសត្វស្លាប សត្វចតុបាទដែលធ្ទើសជាងឆ្មាដែលគេមិនហូបសាច់វា។ ច្បាប់របស់វា ធាតុ ហើយគ្រប់ផ្នែកទាំងនៃខ្លួនរបស់វា កាកសំណល់វាគឺជាណាជិសដូចជាទឹកនោមវា លាមកវា ទឹកមាត់វា ទឹកកាមវា ទឹកដោះវា និងសម្បោរវា និងកម្អួតវា។ |
| | ស្អាត | ១.មនុស្ស ច្បាប់វា គ្រប់កាកសំណល់របស់មនុស្សស្អាតដូចជាទឹកកាម ទឹកមាត់ ទឹកដោះ សម្បោរ រំអិលស្ត្រី។ លើកលែងតែ ទឹកនោម លាមក ម៉ាហ្សី វ៉ាទី និងឈាមទាំងអស់គឺជាណាជិស។<br>២.គេហូបសាច់ ច្បាប់វា គ្រប់កាកសំណល់របស់វាស្អាតដូចជាទឹកនោម លាមក ទឹកកាម ទឹកដោះ ញើស ទឹកមាត់ កម្អួត និងម៉ាហ្សីរបស់វា។<br>៣.អ្វីដែលពិបាកបង្ការខ្លួនពីវា ដូចជាសត្វលា ឆ្មា និងអ្វីដែលតូចជាងវា ដូចជាកណ្តុរ។ល។ ច្បាប់វា ទឹកមាត់ និងញើសវាតែប៉ុណ្ណោះដែលស្អាត។ |

| | | |
|---|---|---|
| | សាកសព | គ្រប់សាកសពទាំងអស់ណាជិស លើកលែងតែសាកសពមនុស្ស ត្រី កណ្តុប និងអ្វីដែលគ្មានឈាមហូរដូចជា ខ្យាដំរី រុយ មុស សត្វទាំងអស់នេះគឺស្អាត។ |
| | វត្ថុរឹង | ដី ថ្ម ។ល។ ច្បាប់វា ស្អាត (លើកលែងតែវត្ថុរឹងដែលមកពីធាតុខាងលើ )។ |

<u>**អត្ថប្រយោជន៍របស់វា៖**</u> *ឈាម ទឹករងៃ និងខ្ទុះគឺណាជិស។ តែគេអនុគ្រោះនៅពេលសឡាតនិងពេលផ្សេងទៀត បើវាប្រឡាក់តិចតួចចេញពីសត្វដែលជ្រះស្អាត។ ***ឈាមដែលស្អាតមានពីរប្រភេទ៖**

១. ត្រី ២.ឈាមដែលនៅជាបសាច់និងសរសៃរនៃសត្វដែលគេសម្លេះ។

*សាច់ដែលគេកាត់ចេញពីសត្វដែលនៅរស់ ដុំឈាម និងសាច់វាគឺជាណាជិស។

*ការសម្អាតណាជិសមិនចាំបាច់នៀតទេ ទោះជ្រះស្អាតដោយទឹកភ្លៀងក៏ដោយគឺវាស្អាតហើយ។ *ប៉ះណាជិសដោយដៃឬជាន់លើវាមិនធ្វើឱ្យខូចទឹកវូហ្គុកទេ តែចាំបាច់ត្រូវតែលាងវានិងលាងសម្អាតអ្វីដែលនៅជាប់ខ្លួន និងសម្លៀកបំពាក់។

***ការសម្អាតរបស់ដែលណាជីលមានលក្ខខ័ណ្ឌដូចតទៅនេះ :** ១. ត្រូវសម្អាតនឹងទឹកស្អាត។ ២. មិនត្រូវពូតក្នុងទឹក បើសិនជារបស់ផ្សេងដែលត្រូវពូតដែរ។ ៣. ត្រូវសម្អាតដោយបោកគក់។ល។ បើការលាងមិនទាន់គ្រប់គ្រាន់នោះ។ ៤. ត្រូវលាងសម្អាតចំនួនប្រាំពីរដង ហើយទីប្រាំបីជាមួយនឹងធូលីឬសាប៊ូ បើសិនជាណាជិសសត្វឆ្កែ។

<u>**កំណត់សម្គាល់ :**</u> ណាជិសនៅលើដី បើសិនជាវាវារ ដូចជាទឹកនោម គ្រាន់តែចាក់ទឹកស្រោចលើវារហូតដល់អស់ពណ៌និងក្លិនរបស់វាជាការស្រេច។ តែបើសិនជារូបធាតុដូចជាលាមកចាំបាច់ត្រូវកើបវាចេញ។

*បើមិនអាចសម្អាតវាបានក្រៅពីទឹក គឺចាំបាច់ត្រូវតែលាងសម្អាតវា។ *បើសិនបាត់ស្នាមនៅកន្លែងប្រឡាក់ណាជិស គឺត្រូវលាងកន្លែងនោះរហូតដល់ប្រាកដក្នុងចិត្តថាវាស្អាត។ *ជនណាយកទឹកវូហ្គុដើម្បីសឡាតសូណាត់គឺគេអនុញ្ញាតឱ្យសឡាតហ្វារហ្ជូនឹងទឹកវូហ្គុ។ *ចំពោះអ្នកដេកលក់ឬលេចផោមពុំត្រូវលាងសម្អាតទេ ព្រោះផោមជារបស់ដែលស្អាត តែបើគេចង់សឡាតគេគ្រាន់តែយកទឹកវូហ្គុជាការស្រេច។

# ច្បាប់ឈាមធម្មជាតិរបស់ស្ត្រី

## ១.ឈាមរដូវនិងឈាមជំងឺ

| បញ្ហា | ច្បាប់ |
|---|---|
| អាយុតិចបំផុត និង ច្រើនបំផុតនៃការមកដូវរបស់ស្ត្រី | តិចបំផុតប្រាំបួនឆ្នាំ។ បើសិនជាស្ត្រីមានឈាមមកមុនអាយុនេះគឺជាឈាមជំងឺ។ ចំពោះអាយុច្រើនបំផុតគឺគ្មានការកំណត់។ |
| ចំនួនថ្ងៃតិចបំផុតនៃការមករដូវ | មួយថ្ងៃមួយយប់(២៤ម៉ោង)។បើតិចជាងនោះគឺជាឈាមជំងឺ។ |
| ចំនួនថ្ងៃច្រើនបំផុតនៃការមករដូវ | ចំនួនដប់ប្រាំថ្ងៃ។ បើឈាមនៅតែបន្តមកលើសពីចំនួននេះគឺជាឈាមជំងឺ។ |
| ភាពជ្រះស្អាតចន្លោះពេលនៃការមករដូវពីរដង | ចំនួនដប់បីថ្ងៃ។បើឈាមនោះជ្រះស្អាតមុនពេលកំណត់របស់វាគឺជាឈាមជំងឺ[1]។ |
| ការមករដូវរបស់ស្ត្រីភាពច្រើ | ចំនួនប្រាំមួយឬប្រាំពីរថ្ងៃ។ |
| ភាពជ្រះស្អាតរបស់ស្ត្រីភាគច្រើន | ចំនួនម្ភៃបីថ្ងៃ ឬម្ភៃបួនថ្ងៃ។ |
| តើឈាមមកក្នុងអំឡុងពេលមានផ្ទៃពោះជាឈាមរដូវដែរឬទេ? | ឈាម ឬឈាមពណ៌ក្រមៅ[2] ឬឈាមពណ៌លឿង[3] ដែលហូរចេញពីស្ត្រីដែលមានផ្ទៃពោះគឺជាឈាមជំងឺ។ |
| តើពេលណាដឹងស្ត្រីមករដូវដឹងថានាងជ្រះ | ស្ត្រីមានពីរប្រភេទ :<br>១.នៅពេលឃើញមានធ្លាក់រំអិលពណ៌ស[4]។ |

---

[1]ឈាមរដូវ គឺជាឈាមធម្មជាតិមានពីកំណើត មានសុខភាពល្អ មិនមែនមានមូលហេតុឆ្លងទន្លេ។ **ឈាមជំងឺគឺជាឈាមដែលមកខុសពេលដោយសារមូលហេតុជំងឺ និងវាខូច។ ខុសគ្នារវាងឈាមរដូវនិងឈាមជំងឺ** ១.ឈាមរដូវពណ៌ក្រហមចាស់ ស្រដៀងនឹងពណ៌ខ្មៅ ហើយឈាមជំងឺក្រហមប្រាសដូចឈាមច្រមុះ។ ២.ឈាមរដូវខាប់ ហើយដុំៗ រីឯឈាមជំងឺវិញរាវហូរចេញមកដូចហូរចេញពីមុខរបួស។ ៣.ឈាមរដូវភាគច្រើនមានកិនអាក្រក់ស្អុយ។ រីឯឈាមរដូវឈាមជំងឺវិញវាមានក្លិនឆ្អាបដូចឈាមធម្មតា។
ចំពោះឈាមរដូវច្បាប់ហាមដូចជា រួមដំណេក លែងលះ សឡាត បួស តវ៉ាហ្វ សូត្រអាល់គួរអាន កាន់អាល់គួរអាន ឋិតនៅក្នុងម៉ាស្ជិត។

[2] ឈាមក្រមៅហូរចេញពីមាត់ទ្វាររបស់ស្ត្រីមានពណ៌កាហ្វេចាស់។

[3] ឈាមពណ៌លឿងហូរចេញពីមាត់ទ្វារស្ត្រីមានពណ៌រាងលឿន។

[4] គឺរំអិលពណ៌សចេញពីមាត់ទ្វារស្ត្រីនៅពេលជ្រះស្អាត។ រំអិលពណ៌សនេះស្អាត តែ



| | |
|---|---|
| ស្អាត? | ២.ស្នូតមាត់ទ្វារពីឈាមឈាមក្រមៅនិងឈាមពណ៌លឿង បើទោះជាមិនឃើញធ្លាក់រំអិលពណ៌សក៏ដោយ។ |
| រំអិលហូរចេញពីប្រដាប់ភេទរបស់ស្ត្រីក្នុងអំឡុងពេលជ្រះស្អាត | បើសិនជាវាថ្លាសស្អិតគឺស្អាត។ តែបើសិនជាឈាមឬរំអិលពណ៌ក្រម៉ៅឬរំអិលពណ៌លឿងគឺណាជិស។ សារជាតុទាំងនេះធ្វើឱ្យខូចទឹករូប្ជ តែបើសិនជាបន្តហូរហូតគឺជាឈាមជំងឺ។ |
| រំអិលពណ៌ក្រម៉ៅ ឬពណ៌លឿងចេញតាមមាត់ទ្វាររបស់ស្ត្រី | បើសិនជាវាជាប់នឹងការមករដូវ មុនឬក្រោយមករដូវគឺជាឈាមរដូវ។តែបើគ្មានការពាក់ព័ន្ធទេគឺជាឈាមជំងឺ។ |
| ស្ត្រីដែលមានរដូវជារៀងរាល់ខែហើយជ្រះស្អាតមុនគម្រប់ថ្ងៃរបស់វា | ច្បាប់សម្រេចថានាងជ្រះស្អាត បើសិនជាអស់ឈាមហើយឃើញស្អាត បើទោះជាមិនទាន់គ្រប់ថ្ងៃរបស់វាក៏ដោយ។ |
| មករដូវមុន ឬក្រោយថ្ងៃដែលធ្លាប់មកតាមធម្មតា | អ្វីដែលបញ្ជាក់ពីលក្ខណៈឈាមរដូវ។ មករដូវពេលណាក៏បាន សំខាន់ចម្លោះឈាមទាំងពីរមានរយៈពេលច្រើនជាង១៣ថ្ងៃ (រយៈពេលស្អាតដែលតិចបំផុត)។ បើពុំនោះទេវាជាឈាមជំងឺ។ |
| បើមករដូវលើសឬតិចជាងចំនួនថ្ងៃដែលធ្លាប់មក។ | វាគឺជាឈាមរដូវ ដោយមានលក្ខខណ្ឌ មិនត្រូវសើលពីរយៈពេលមករដូវដែលច្រើនបំផុត(១៥ថ្ងៃ)។ |
| បើសិនជាស្ត្រីមានឈាមហូរពេញមួយខែឬលើសពីនោះ | មានករណីច្រើនយ៉ាង :<br>១.បើនាងបានដឹងពីពេលមករដូវរបស់នាងក្នុងខែនីមួយៗ ឬចំនួនថ្ងៃ គឺនាងសម្រាកក្នុងចំនួនថ្ងៃ ឬពេលនោះ ដ្បិតឈាមនោះអាចបែងចែកបាន ឬមិនបែងចែកបាន។<br>២.បើនាងបានដឹងពីពេលវេលានិងរយៈពេល ក៏ប៉ុន្តែមិនដឹងចំនួនថ្ងៃ។ ដូច្នេះនាងសម្រាករយៈពេល៦ឬ៧ថ្ងៃ(ចំនួនភាគច្រើននៃការមករដូវ)ដូចថ្ងៃដែលគេដឹងពីចំនួនរបស់វា។<br>៣.ដឹងពីចំនួនថ្ងៃនៃការមករដូវ តែមិនដឹងពីពេលនៃការមករដូវក្នុងមួយខែ។ ដូច្នេះនាងត្រូវសម្រាកក្នុងចំនួនថ្ងៃដែលនាងដឹងនៅដើមខែចន្ទគតិ។ |

ធ្វើឱ្យដាច់ទឹករូប្ជ។

# ទី២ ឈាមឆ្លងទន្លេ

| បញ្ហា | ច្បាប់សម្រេច |
|---|---|
| នៅស្រ្តីឆ្លងទន្លេ តែគ្មានឃើញ ឈាម | នាងមិនត្រូវអនុវត្តតាមច្បាប់ឈាមឆ្លងទន្លេទេ។ នាងមិនចាំបាច់ ត្រូវមុជទឹកសម្អាតខ្លួន ហើយបួសរបស់នាងក៏អត់ខូចដែរ។ |
| នៅពេលឃើញមានសញ្ញាឆ្លងទន្លេ | អ្វីដែលនាងបានឃើញមានឈាម និងទឹកភ្លោះជាមួយនឹងមានការឈឺចាប់មុនពេលកើតកូន គឺគេចាត់ចូលក្នុងច្បាប់ឈាមឆ្លងទន្លេនោះទេ តែចាត់ចូលក្នុងច្បាប់ឈាមជំងឺ។ |
| ឈាមដែលចេញពីស្រ្តីអំឡុងពេលឆ្លងទន្លេ | នេះគឺជាឈាមឆ្លងទន្លេ ទោះបីមិនទាន់កើតកូនចេញមកឬចេញអវៈយវៈខ្លះក៏ដោយ។ មិនត្រូវឱ្យនាងសឡាតសងវិញសម្រាប់ការខកខានសឡាតក្នុងអំឡុងពេលនេះទេ។ |
| តើពេលណាគេចាប់រាប់ថ្ងៃឆ្លងទន្លេ | បន្ទាប់ពីកូនកើតចេញពីផ្ទៃម្តាយរួចរាល់។ |
| ចំនួនឈាមឆ្លងទន្លេតិចបំផុត | គ្មានការកំណត់សម្រាប់ចំនួនតិចបំផុត។ បើសិនជានាងកើតកូនរួច គ្មានឈាមធ្លាក់ គឺចាំបាច់ត្រូវឱ្យនាងមុជទឹកសម្អាតខ្លួននិងសឡាតធម្មតាវិញ ហើយមិនចាំបាច់រង់ចាំគម្រប់៤០ថ្ងៃនោះទេ។ |
| ចំនួនឈាមឆ្លងទន្លេច្រើនបំផុត | ចំនួន៤០ថ្ងៃ តែបើសើលពីនោះគេមិនចាត់ទុកជាឈាមឆ្លងទន្លេទេ។ ចាំបាច់ត្រូវសម្អាតខ្លួនហើយសឡាត។ លើកលែងតែចំពេល មកឈាមរដូវមុននឹងមានផ្ទៃពោះប៉ុណ្ណោះ គឺគេចាត់ទុកជាឈាមរដូវ។ |
| ស្ត្រីកើតបានកូនភ្លោះ និងលើសពីនេះ | ចាប់រាប់បន្ទាប់ពីសម្រាលកូនទីមួយរួច។ |
| ឈាមបន្ទាប់ពីរលូតកូន | បើសិនជាអាយុកូនដែលរលូតនោះចាប់ពី៨០ថ្ងៃចុះ គឺជាឈាម ឈឺជំងឺ។ តែបើសិនជាកូនដែលរលូត |

| | |
|---|---|
| | នោះមានអាយុក្រោយ៩០ថ្ងៃ គឺជាឈាមឆ្លងទន្លេ។ តែបើនៅចន្លោះពី៨០ទៅ៩០ថ្ងៃ ច្បាប់របស់វាទាក់ទងនឹងកំណើតរបស់វា។ បើសិនជាក្លាយជារូបរាងមនុស្សហើយនោះ គឺជាឈាមឆ្លងទន្លេ តែបើមិនទាន់កើតជារូបរាងទេ គឺជាឈាម ជំងឺ។ |
| បើជ្រះស្អាតក្នុងអំឡុងពេល៤០ថ្ងៃបន្ទាប់មកឈាមក៏ធ្លាក់មកម្តងទៀតមុននឹងគម្រប់ពេលកំណត់របស់វា | អ្វីដែលស្ត្រីបានឃើញពីភាពជ្រះស្អាតក្នុងអំឡុងពេល៤០ថ្ងៃ គឺចាត់ទុកថាជ្រះស្អាតត្រូវឱ្យនាងមុជទឹកសម្អាតខ្លួននិងសឡាតជាធម្មតា។តែបើវាមានមកវិញក្នុងអំឡុងពេល៤០ថ្ងៃនោះ គឺចាត់ចូលក្នុងច្បាប់ឈាមឆ្លងទន្លេ ច្បាប់កំណត់បែបនេះរហូតដល់ផុត៤០ថ្ងៃ។ |

<u>កំណត់សម្គាល់</u>

✸ចាំបាច់លើស្ត្រីមានឈាមជំងឺត្រូវសឡាត។ ក៏ប៉ុន្តែនាងត្រូវយកទឹកវូហ្ទរៀងរាល់ពេលសឡាត។

✸ បើសិនជាស្ត្រីជ្រះស្អាតពីឈាមរដូវ ឬឈាមឆ្លងទន្លេមុនថ្ងៃលិច ចាំបាច់នាងត្រូវសឡាតហ្ស៊ូហ្ស និងអាសើរនៅថ្ងៃនោះ។ បើសិនជានាងជ្រះស្អាតមុនអារុណរះនាងត្រូវសឡាតម៉ាគ្រិប អ៊ីស្ហា នៅយប់នោះ។

✸ បើសិនជាដល់ម៉ោងសឡាត បន្ទាប់មកនាងមករដូវ ឬមានឈាមឆ្លងទន្លេមុនសឡាត គឺនាងត្រូវសឡាតសងវិញក្រោយពេលជ្រះស្អាត។

✸ ចាំបាច់លើស្ត្រីត្រូវស្រាយផ្នួងសក់នៅពេលមុជទឹកសម្អាតឈាមរដូវ ឬឈាមឆ្លងទន្លេ។ រីឯមុជទឹកជូណុបវិញពុំត្រូវស្រាយផ្នួងសក់នោះទេ។ ច្បាប់កំណត់មឹករ៉ួសរួមដំណេកពេលស្ត្រីមានឈាមជំងឺ។ តែគេអនុញ្ញាតនៅពេលប្តីមានតម្រូវការក្នុងរឿងនេះ។

✸ចាំបាច់លើស្ត្រីមានឈាមជំងឺត្រូវយកទឹកវូហ្ទសម្រាប់រៀងរាល់ពេលសឡាតបន្ទាប់ពីមុជទឹកសម្អាតឈាមឆ្លងទន្លេរួចរហូតដល់អស់ឈាម។ គេអនុញ្ញាតឱ្យស្ត្រីលេបថ្នាំឃាត់ឈាមរដូវបណ្តោះអាសន្នដើម្បីបំពេញអ៊ីហ្គាហ្វាត់បុណ្យហាជ្ជនិងអុំរ៉ោះ ឬបួសឱ្យចប់មួយខែរ៉ម៉ាហ្ទន។ តែត្រូវមានលក្ខខណ្ឌធានាថា ថ្នាំនោះមិនបង្កគ្រោះថ្នាក់ដល់នាង។

# ស្ត្រីក្នុងឥស្លាមៈ

ស្ត្រីដូចបុរសដែរក្នុងការទទួលផលបុណ្យនៅចំពោះអល់ឡោះ អាស្រ័យលើជំនឿ និងការប្រតិបត្តិ។ អ្នកនាំសារអល់ឡោះបានមានប្រសាសន៍ថាៈ មានន័យថា «**ស្ត្រីជាបងប្អូនបង្កើតរបស់បុរស**»។ (អាពូទើវូទ)

ស្ត្រីមានសិទ្ធិទាមទារសិទ្ធិរបស់ខ្លួន ឬរកយុត្តិធម៌ដែលគេប្រព្រឹត្តិបំពានលើនាង។ ពីព្រោះសេចក្តីថ្លែងការសាសនាទៅកាន់ប្រុស និងស្រីគឺស្មើភាពគ្នា។ លើកលែងតែអ្វីដែលច្បាប់ចែងថាត្រូវបែងចែក ហើយជាច្បាប់ដែលតិចតួចបំផុត បើប្រៀបធៀបនឹងច្បាប់ផ្សេងៗ។ ពីព្រោះច្បាប់ស្ហារីអាត់ឥស្លាមរក្សានូវលក្ខណៈពិសេសរបស់បុរស និងស្ត្រីផ្នែកខាងរូបសម្បត្តិ និងសមត្ថភាព។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា ៈ﴿أَلَا يَعْلَمُ مَنْ خَلَقَ وَهُوَ ٱللَّطِيفُ ٱلْخَبِيرُ﴾

មានន័យថា «**ពិតណាស់ អល់ឡោះដែលបានបង្កើតសត្វលោកទ្រង់ដឹង ហើយទ្រង់ល្អិតល្អន់ និងដឹងយ៉ាងច្បាស់លាស់**»។(អាល់មុលក៍ ៖ ១៤)

ស្ត្រីមានមុខងារតួនាទីដោយឡែករបស់ខ្លួន ហើយបុរសក៏មានមុខងារតួនាទីដោយឡែករបស់ខ្លួនផងដែរ។ លើសពីនេះ ការលូកដៃក្នុងអ្វីដែលជាលក្ខណពិសេសរបស់អ្នកដទៃគឺនាំឱ្យប៉ះពាល់ដល់តុល្យភាពនៃជីវិត។ តាមពិត គេឱ្យផលបុណ្យស្ត្រីដូចបុរសដែរ ហើយនាងនៅក្នុងផ្ទះរបស់នាង។

មានន័យថា «**អំពីអើស្មាក ពិន យ៉ាហ្សីតបាននិយាយថា គាត់បានមកជួបណាពីខណៈដែលគាត់នៅជាមួយសហាហ្ពាត់របស់គាត់។ គាត់បាននិយាយថា ខ្ញុំសុខចិត្តលះបង់ឪពុកម្តាយដើម្បីលោក។ ខ្ញុំជាស្ត្រីដែលមកជួបលោក ខ្ញុំប្រកាសថាខ្លួនខ្ញុំពលីដើម្បីលោក។ ពិតណាស់គ្មានស្ត្រីណាម្នាក់នៅទិសខាងកើត និងនៅទិសខាងលិចបានឮពីការចេញដំណើររបស់ខ្ញុំ ឬមិនបានឮគឺគេសុទ្ធតែមានគំនិតដូចខ្ញុំដែរ។ ពិតណាស់ អល់ឡោះបញ្ជូនលោកមកដោយសច្ចភាពទៅកាន់បុរសនិងស្ត្រី។ ពួកយើងបានមានជំនឿចំពោះលោក និងមានជំនឿចំពោះម្ចាស់ដែលបានបញ្ជូនលោកមក។ ពួកយើងខ្ញុំដែលជាស្ត្រីនេះនៅតែក្នុងផ្ទះ មិនអាចសម្លឹងមើលទៅឆ្ងាយអង្គុយនៅតែក្នុងផ្ទះ បំពេញតណ្ហារបស់ប្តី ពរពោះកូនៗរបស់ពួកអ្នក។ ពិតណាស់ប្រុសៗទាំងឡាយពួកអ្នកប្រសើរជាងពួកយើង ដោយការសឡាតជុំអាត់ និងសឡាតចាម៉ាអះ ទៅសួរសុខទុក្ខអ្នកជំងឺ ចូលរួមហែរសព ធ្វើបុណ្យហាំជ្ជម្តងហើយម្តងទៀត ហើយជាពិសេសគឺចេញទៅច្បាំងក្នុងផ្លូវអល់ឡោះ។ ក្នុងចំណោពួកអ្នក បើ**



**មានបុរសណាម្នាក់ចេញទៅធ្វើបុណ្យហាជ្ជ ឬអុំរ៉ោះ ឬទៅឈរជើងនៅសមរភូមិ គឺពួកយើងជាអ្នកថែរក្សាទ្រព្យសម្បត្តិរបស់ពួកអ្នក និងដេប៉ាក់អាវសម្រាប់ពួកអ្នក ពួកយើងអប់រំកូនចៅរបស់ពួកអ្នក។ បពិត្រអ្នកនាំសារអល់ឡោះ តើពួកយើងមិនអាចរួមចំណែកជាមួយពួកអ្នកក្នុងផលបុណ្យទេឬ? គេបាននិយាយថា អ្នកនាំសារបានងាកទៅកាន់សហការីរបស់គាត់ បន្ទាប់មកគាត់បានមានប្រសាសន៍ថា៖ តើពួកអ្នកឮសំដីស្ត្រីដែលគ្មានសំនួរណាប្រសើរជាងសំនួររបស់នាងទាក់ទងនឹងសាសនារបស់នាងទេ? ពួកគេឆ្លើយថា៖ បពិត្រអ្នកនាំសារអល់ឡោះ ពួកយើងគិតថា គ្មានស្ត្រីណាដែលយល់ច្បាស់ដូចនាងទេ។ ណាពីបែរទៅរកនាងនោះ ហើយតបទៅកាន់នាងវិញថា៖ ចូរនាងត្រលប់ទៅវិញចុះ ចូរប្រាប់ទៅស្ត្រីទាំងឡាយដែលពុំបានមកថា ការស្តាប់បង្គាប់តាមប្តីរបស់ពួកនាង និងការខំប្រឹងប្រែងរបស់នាងដើម្បីបង្គាប់ចិត្តប្តី និងធ្វើតាមអ្វីដែលឯកភាពនឹងប្តីនាងគឺនឹងទទួលបានផលបុណ្យស្មើភាពគ្នាទាំងអស់។ គេនិយាយថា ស្ត្រីនោះបានដើរចេញទៅ ហើយសូត្រតះលីលតឹកពៀរ ដោយទទួលបានដំណឹងល្អនេះ»។** (អាល់ពៃហាគីយ)

លើសពីនេះ គេចាត់ទុកការធ្វើល្អចំពោះសាច់ញាតិដែលជាស្ត្រីភេទគឺនឹងទទួលបានផលបុណ្យឧត្តុង្គឧត្តម។ **មានន័យថា៖** អំពីអាណាស់ ពិន ម៉ាលីកបាននិយាយថា៖ មានស្ត្រីមួយក្រុមបានមកជួបអ្នកនាំសាររបស់អល់ឡោះហើយនិយាយថា៖ បពិត្រអ្នកនាំសារអល់ឡោះ ពួកបុរសគេបានគុណសម្បត្តិដោយការចេញច្បាំងក្នុងផ្លូវអល់ឡោះ។ តើពួកយើងមានអំពើល្អអាចតាមទាន់អំពើល្អរបស់ពួកអ្នកចេញច្បាំងក្នុងផ្លូវអល់ឡោះទេ? អ្នកនាំសារអល់ឡោះបានមានប្រសាសន៍ថា : **«កិច្ចការរបស់ពួកនាងនៅផ្ទះ គឺអាចទាន់អំពើល្អរបស់ពួកអ្នកចេញច្បាំងក្នុងផ្លូវអល់ឡោះ»**។ (អាល់ហ្បែហាគី)

ណាពីគាត់បានមានប្រសាសន៍ថា: មានន័យថា **«នរណាចំណាយលុយលើកូនស្រីពីរនាក់ ឬបងប្អូនស្រីពីរនាក់ ឬសាច់ញាតិស្ត្រីពីរនាក់ហើយប្រាថ្នាការចំណាយនេះដោយចិត្តជ្រះថ្លារហូតដល់អល់ឡោះឱ្យគេទាំងពីរធូរធារ ឬទ្រង់ឱ្យគេទាំងពីរគ្រប់គ្រាន់ គឺស្ត្រីទាំងពីរនេះជារនាំងបាំងភ្លើងនរកសម្រាប់រូបគេ»**។(អះម៉ាត់ និងតប់រ៉នីយ៍)





# ក្បួនច្បាប់ខ្លះរបស់ស្ត្រី

➢ គេហាមមិនឱ្យស្ត្រីនៅតែឯងជាមួយនឹងបុរសចម្លែកដោយគ្មានអ្នកម៉ះរ៉ាម( محرم )[1] នៅជាមួយ។ណាពីបានមានប្រសាសន៍ថា : មានន័យថា «**បុរសម្នាក់ពុំត្រូវនៅតែឯងជាមួយស្ត្រីលុះត្រាតែមានបុរសមះរ៉ាមនៅជាមួយ**»។(អាល់ពូខរី និងមូស្លីម)

➢ គេអនុញ្ញាតឱ្យស្ត្រីសឡាតនៅក្នុងម៉ាស្ជិត។ តែបើសិនជាគេខ្លាចមានវិបត្តិ(ហ្វិតណះ) គឺមឹករ៉ោះ។ អាអ៊ីស្ហះបាននិយាយថា៖ មានន័យថា៖ បើសិនជាអ្នកនាំសារអល់ឡោះទាន់នូវអ្វីដែលស្ត្រីបានប្រឌិតឡើងថ្មីៗគឺគាត់នឹងហាមឃាត់ពួកនាងពីម៉ាស្ជិត។ ដូចជាគេបានហាមចំពោះស្ត្រីអ៊ិស្រាអែល។(អាល់ពូខរី និងមូស្លីម)

ក៏ដូចគ្នាដែរសឡាតរបស់បុរសនៅវិហារទទួលបានផលបុណ្យទ្វេដង ដូចគ្នាដែរសឡាតរបស់ស្ត្រីនៅផ្ទះរបស់នាងទទួលបានផលបុណ្យទ្វេដង។ មានស្ត្រីម្នាក់បានមកជួបណាពី ហើយបាននិយាយថា: មានន័យថា «បពិត្រអ្នកនាំសារអល់ឡោះ ពិតណាស់ខ្ញុំពេញចិត្តចង់សឡាតជាមួយលោក។ គាត់បានមានប្រសាសន៍ថា៖ **ពិតណាស់ ខ្ញុំដឹងថា អ្នកពេញចិត្តចង់សឡាតជាមួយខ្ញុំ ហើយសឡាតរបស់អ្នកនៅផ្ទះរបស់អ្នកប្រសើរជាងសឡាតរបស់អ្នកក្នុងបន្ទប់របស់អ្នក ហើយសឡាតក្នុងបន្ទប់របស់អ្នកប្រសើរជាងសឡាតក្នុងបរិវេណផ្ទះរបស់អ្នក ហើយអ្នកសឡាតក្នុងបរិវេណផ្ទះរបស់អ្នកប្រសើរជាងនៅម៉ាស្ជិតក្រុមរបស់អ្នក ហើយសឡាតនៅម៉ាស្ជិតក្រុមរបស់អ្នកប្រសើរជាងសឡាតក្នុងម៉ាស្ជិតក្រុមរបស់ខ្ញុំ**»។(អះម៉ាត់)

ណាពីបានមានប្រសាសន៍ទៀតថា៖ មានន័យថា «**ម៉ាស្ជិតដែលប្រសើរបំផុតសម្រាប់ស្ត្រីគឺផ្ទះរបស់ពួកនាង**»។ (អះម៉ាត់)

➢ បុណ្យហ័ជ្ជ និងអុំរ៉ោះពុំមែនជាកាតព្វកិច្ចលើស្ត្រី លើកលែងតែមានម៉ះរ៉ាមរួមដំណើរទៅជាមួយ។ គេមិនអនុញ្ញាតឱ្យនាងធ្វើដំណើរដោយគ្មានម៉ះរ៉ាម។ ដោយអ្នកនាំសារបានមានប្រសាសន៍ថា : មានន័យថា «**ស្ត្រីពុំត្រូវធ្វើដំណើរលើសពីបីថ្ងៃលើកលែងតែមានអ្នកម៉ះរ៉ាមទៅជាមួយ**»។ (អាល់ពូខរីមូស្លីម)

➢ គេហាមស្ត្រីទៅហ្សីយ៉ារ៉ះផ្នូរ និងហែរសព ដោយណាពីគាត់បានមានប្រសាសន៍ថា : មានន័យថា «**អល់ឡោះដាក់ផ្តាសាចំពោះស្ត្រីដែលទៅហ្សីយ៉ារ៉ះ**

---

[1] ម៉ះរ៉ាមរបស់ស្ត្រីគឺអ្នកដែលច្បាប់មិនអនុញ្ញាតឱ្យរៀបការជាមួយនាងជាដរាបដូចជាឪពុក តានិងរាប់ឡើងលើ។ កូន ចៅនិងរាប់ចុះក្រោម។ បងប្អូនប្រុស និងក្មួយប្រុសបង្កើត មាខាងឪពុក មាខាងម្តាយ កូនចុងនិងរាប់ឡើងលើ។ កូនចុងនិងរាប់ចុះក្រោម។ ឪពុក កូន បងប្អូនរួមមេដោះ កូនប្រសាប្រុស និងឪពុកចុង។



**ផ្ទះ**»។ (អាត់តៀរមីហ្ស៊ី និងអ៊ីបនូម៉ាយ៉ះ)
អ៊ុំអាទីយ៉ះបាននិយាយថា៖ មានន័យថា «**គេហាមយើងពីការហែរតាមសព ហើយគាត់មិនហាមពួកយើងដាច់ខាតនោះទេ**»។(មូស្លីម)

➤ គេអនុញ្ញាតឱ្យស្ត្រីលាបថ្នាំសក់ ពណ៌អ្វីក៏បាន ហើយពណ៌ខ្មៅមឹករ៉េះ ក្នុងលក្ខខណ្ឌមិនមែនបន្លំភ្នែកអ្នកមកចូលស្តីដណ្តឹង។

➤ ចាំបាច់ត្រូវផ្តល់ចំណែកមត៌កដែលអល់ឡោះបានកំណត់ឱ្យនាង។ ច្បាប់ស្ហាវីអាត់ហាមមិនឱ្យឃាត់នាងពីការទទួលទ្រព្យមត៌ក។ មានរីវ៉ាយ៉ាត់អំពីណាពីបានមានប្រសាសន៍ថា: មានន័យថា «**អ្នកណាកាត់ផ្តាច់ទ្រព្យមត៌កពីអ្នកត្រូវទទួលមត៌កគឺអល់ឡោះនឹងកាត់មត៌ករបស់គេពីឋានសួគ៌នៅថ្ងៃបរលោក**»។ (អ៊ីបនូម៉ាយ៉ះ)

➤ ចាំបាច់លើប្តីត្រូវចំណាយលើប្រពន្ធនូវអ្វីដែលជាតម្រូវការចាំបាច់របស់នាងដូចជាម្ហូបអាហារ សម្លៀកបំពាក់ កន្លែងស្នាក់នៅដោយសេចក្តីល្អ។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា៖﴿لِيُنفِقۡ ذُو سَعَةٖ مِّن سَعَتِهِۦۖ وَمَن قُدِرَ عَلَيۡهِ رِزۡقُهُۥ فَلۡيُنفِقۡ مِمَّآ ءَاتَىٰهُ ٱللَّهُۚ﴾
មានន័យថា «**ចូរឱ្យអ្នកដែលមានជីវភាពធូរធារ ចំណាយឱ្យសមរម្យអំពីទ្រព្យសម្បត្តិរបស់គេ រីឯអ្នកដែលទ្រព្យសម្បត្តិរបស់គេមានកំណត់ ចូរឱ្យគេចំណាយតាមអ្វីដែលអល់ឡោះជាម្ចាស់បានប្រទានឱ្យគេ**»។ (អាត់តឡាគ : ៧)

បើសិនជាស្ត្រីនោះគ្មានប្តីទេ ជាកាតព្វកិច្ចរបស់ឪពុកនាង ឬបងនាង ឬកូននាងត្រូវចំណាយលើនាង។ បើសិនជានាងគ្មានសាច់ញាតិទេ គប្បីមនុស្សទាំងឡាយត្រូវចំណាយលើនាងដោយយោងតាមហាទីសថា : មានន័យថា «**អ្នកដែលដើរជួយស្ត្រីមេម៉ាយ និងអ្នកក្រីក្រគឺដូចអ្នកដែលតស៊ូក្នុងផ្លូវអល់ឡោះឬដូចអ្នកដែលងើបសឡាតពេលយប់ និងបួសពេលថ្ងៃ**»។ (អាល់ពូខរី និងមូស្លីម)

➤ ស្ត្រីមានសិទ្ធិចិញ្ចឹមបីបាច់កូនតូចជាងនរណាទាំងអស់ ដរាបណានាងមិនទាន់យកប្តី។ ឪពុកកូននោះត្រូវចំណាយលើម្តាយ ដរាបណាកូននោះនៅជាមួយម្តាយ។

➤ ស្ត្រីមិនគប្បីចាប់ផ្តើមឱ្យសាឡាមមុន ជាពិសេសបើសិនជានាងនៅក្រមុំ ឬនាងខ្លាចមានហ្វិតណះ។

➤ នាងចាំបាច់កោររោមថ្លាសក្រោមផ្ចិត ដករោមក្លៀក កាត់ក្រចកនៅរៀងរាល់ថ្ងៃសុក្រ ហើយពុំត្រូវទុកលើសពី៤០ថ្ងៃ។

➤ គេហាមដករោមមុខ និងចិញ្ចើមទាំងពីរ។ ដោយអ្នកនាំសារបានមានប្រសាសន៍ថា: មានន័យថា «**អល់ឡោះជាម្ចាស់ដាក់ផ្តាសាចំពោះស្ត្រីដែលសម្អាតរោមមុខគេ និងស្ត្រីដែលឱ្យគេសម្អាតរោមមុខ**»។(អាពូទើវ៉ូទ)

➤ **ការកាន់ទុក្ខ** គេហាមស្ត្រីកាន់ទុក្ខលើសពីបីថ្ងៃចំពោះសាកសព លើកលែងតែ




ប្តីរបស់នាង ដោយអ្នកនាំសារបានមានប្រសាសន៍ថា មានន័យថា «**គេមិនអនុញ្ញាតឱ្យស្ត្រីដែលមានជំនឿចំពោះអល់ឡោះ និងថ្ងៃបរលោកកាន់ទុក្ខលើសាកសពលើសពីបីយប់ លើកលែងតែចំពោះប្តីរបស់នាង**»។(មូស្លីម)
ចាំបាច់លើនាងត្រូវកាន់ទុក្ខលើប្តីរបស់នាងរយៈពេល៤ខែ១០ថ្ងៃ។ ក្នុងពេលកាន់ទុក្ខនេះនាងពុំត្រូវតុបតែងខ្លួន ប្រើគ្រឿងក្រអូបដូចជារមៀត និងពាក់គ្រឿងអលង្ការ សូម្បីតែចិញ្ចៀន។ ពាក់អាវពណ៌តុបតែងខ្លួនដូចជាពណ៌ក្រហម និងពណ៌លឿង និងតុបតែងខ្លួនដោយលាបក្រពេន ឬធ្វើមេកអាប់ ឬលាបត្របកភ្នែក។ គេអនុញ្ញាតឱ្យនាងកាត់ក្រចក ដករោម និងមុជទឹក។ ក៏មិនចាំបាច់ពាក់សម្លៀកបំពាក់កាន់ទុក្ខពណ៌ខ្មៅជាកំណត់ដែរ។ នាងចាំបាច់កាន់អិតហ្ទះនៅផ្ទះដែលប្តីនាងបានស្លាប់ ហើយនាងនៅក្នុងផ្ទះនោះ។ គេហាមប្តូរផ្ទះលើកលែងតែមានការចាំបាច់។ នាងពុំត្រូវចុះពីផ្ទះលើលែងតែមានការចាំបាច់នៅពេលថ្ងៃ។

➤ គេហាមស្ត្រីកោរសក់ដោយគ្មានការចាំបាច់។ គេអនុញ្ញាតឱ្យកាត់សក់ខ្លីដោយមានលក្ខខណ្ឌ ពុំត្រូវតែងខ្លួនធ្វើជាមនុស្សប្រុស។ ដោយយោងលើហាទីសថាៈ មានន័យថា «**អ្នកនាំសារអល់ឡោះដាក់បណ្តាសាចំពោះស្ត្រីណាដែលតែងខ្លួនធ្វើដូចជាមនុស្សប្រុស**»។(អាតតៀរម៉ីហ្ស៊ី) ឬប្រដូចខ្លួននឹងស្ត្រីកាហ្វៀរ ដោយយោងតាមហាទីសថា : មានន័យថា «**នរណាប្រដូចខ្លួននឹងក្រុមណាមួយគឺគេជាក្រុមនោះ**»។(អាពូទើវូទ)

➤ ចាំបាច់លើស្ត្រីត្រូវបិទបាំងខ្លួនប្រាណ នៅពេលចេញពីផ្ទះ ដោយពាក់អាវវែងដែលមានលក្ខខណ្ឌដូចតទៅ **១.** គ្របដណ្តប់ពេញខ្លួន។ **២.** កុំឱ្យអាវនោះបំពាក់ដោយការតុបតែងលម្អ។ **៣.** អាវក្រាស់ មិនស្តើង។ **៤.** ធំទូលាយកុំឱ្យរឹបចង្អៀត។ **៥.**កុំឱ្យអាវនោះមានក្លិនក្រអូប។ **៦.** កុំឱ្យដូចអាវប្រុសៗ។ **៧.** កុំឱ្យដូចអាវពួកកាហ្វៀរ។ **៨.**កុំឱ្យអាវនោះម៉ូដល្បីល្បាញ។ គេហាមពាក់អាវណាដែលមានរូបភាពមនុស្ស ឬសត្វ និងដាក់ព្យួរវា ឬធ្វើជាវាំងនន ឬលក់ដូរវា។

**កេរ្តិ៍ខ្មាសស្ត្រីជាមួយអ្នកដទៃចែកជាបីផ្នែក** **១.** ប្តីខ្លួនឯងអាចធ្វើអ្វីៗតាមចិត្ត។ **២.** ស្ត្រីដូចគ្នា និងអ្នកម៉ះរ៉ាម អាចមើលអ្វីដែលនៅខាងក្រៅដូចជាមុខ សក់ គល់ក ដៃ ដើមដៃ ជើងល។ល។ ៣.បុរសដទៃទៀត មិនអាចមើលអ្វីទាំងអស់ លើកលែងតែចាំបាច់ដូចជាចូលស្តីដណ្តឹង ឬព្យាបាល។ល។ ពីព្រោះហ៊ិតណះរបស់ស្ត្រីនៅលើមុខរបស់នាង។ ពិតណាស់ហ្វាទីម៉ះ ពិនត៍ មុនហ្សៀរបាននិយាយថា ពួកយើងគ្របមុខរបស់យើងមិនឱ្យប្រុសៗឃើញ។ រីវ៉ាយ៉ាត់ហាកិម។ អាអ៊ីស្ហះបាននិយាយថាៈ មានន័យថា «**មានពួកអ្នកដំណើរឆ្លងកាត់ពួកយើង ហើយពួកយើងនៅជាមួយនឹងអ្នកនាំសាររបស់អល់ឡោះជាប្រពន្ធគាត់។ នៅពេលពួកគេ**



**មកដល់ក្បែរពួកយើង យើងម្នាក់ៗទាញអាវគ្របក្បាលដល់មុខរបស់យើង លុះពួកគេទៅផុតយើងបើកមុខវិញ**»។(អាពូទើវ៉ូទ)

➤ អិតហ្វះមានច្រើនប្រភេទ ១. មានផ្ទៃពោះ អិតហ្វះលែងលះ និងប្តីស្លាប់គឺរហូតដល់កើតកូនរួច។ ២.ប្តីស្លាប់ចោល អិតហ្វះរបស់នាង៤ខែ១០ថ្ងៃ។ ៣.ប្តីលែងពេលកំពុងមករដូវ អិតហ្វះរបស់នាងមករដូវបីដង ហើយផុតកំណត់ពេលស្អាតខ្លួនពីការមករដូវលើកទី៣។ ៤. ស្ត្រីគ្មានរដូវ អិតហ្វះរបស់នាងបីខែ។ អិតហ្វះស្ត្រីប្តីលែងត្រលប់វិញ គឺចាំបាច់ត្រូវនៅជាមួយប្តីក្នុងពេលកំពុងកាន់អិតហ្វះ ហើយអនុញ្ញាតឱ្យមើលអ្វីដែលប្តីចង់មើលចំពោះរូបនាង។ ត្រូវនៅជាមួយនាងរហូតដល់អស់អិតហ្វះ សង្ឃឹមថា អល់ឡោះឱ្យគេទាំងពីរជាគ្នាឡើងវិញ។ ការវិលមកវិញពុំចាំបាច់ការអនុញ្ញាតពីប្រពន្ធ។ បើសិនជាការលែងលះត្រលប់មកវិញ។ ការត្រលប់មកវិញជាផ្លូវការដោយគ្រាន់តែប្តីពោលថា ខ្ញុំត្រលប់មកជាជាមួយអ្នកវិញហើយ ឬរួមដំណេកជាមួយគ្នា។

➤ ស្ត្រីមិនអាចរៀបការដោយខ្លួនឯងបានទេ។ ដោយយោងតាមប្រសាសន៍អ្នកនាំសារថា : មានន័យថា «**ស្ត្រីណាក៏ដោយរៀបការដោយគ្មានការអនុញ្ញាតពីអាណាព្យាបាលរបស់នាងគឺការរៀបការរបស់នាងជាមោឃៈ**»។(អាពូទើវ៉ូទ)

➤ គេហាមស្ត្រីតសក់ដោយសក់ផ្សេង ឬសាក់ខ្លួនសូម្បីបន្តិចបន្តួច នេះជាអំពើបាបកម្រិតធ្ងន់ ដោយអ្នកនាំសារបានមានប្រសាសន៍ថា : មានន័យថា «**អល់ឡោះបានដាក់ផ្តាសាចំពោះស្ត្រីតសក់ឱ្យគេ និងស្ត្រីគេតសក់ឱ្យ ស្ត្រីចាក់សាក់និងស្ត្រីដែលគេសាក់ឱ្យ**»។(អាល់ពូខរី និងមូស្លីម)

➤ គេហាមស្ត្រីមិនឱ្យសុំប្តីលែងដោយគ្មានមូលហេតុ ដោយអ្នកនាំសារបានមានប្រសាសន៍ថា : មានន័យថា «**ស្ត្រីណាក៏ដោយដែលសុំប្តីលែងដោយគ្មានបញ្ហាធំដុំ គឺនាងត្រូវបានគេហាមពីក្លិនឋានសួគ៌(មិនបានចូលឋានសួគ៌)**»។ (អាពូទើវ៉ូទ)

➤ ចាំបាច់លើស្ត្រីត្រូវស្តាប់បង្គាប់ប្តីនាងនូវអ្វីដែលល្អ ជាពិសេសនៅពេលប្តីហៅទៅរួមដំណេក។ មានន័យថា «**បើសិនជាបុរសម្នាក់ហៅប្រពន្ធខ្លួនមករួមដំណេកហើយនាងបដិសេធមិនព្រម ហើយប្តីគេងលក់ទាំងមានកំហឹងចំពោះនាង គឺទេវតាដាក់បណ្តាសានាងរហូតដល់ព្រឹក**»។(អាល់ពូខរី និងមូស្លីម)

➤ ហាមស្ត្រីប្រើគ្រឿងក្រអូប បើសិនជានាងដឹងថានៅតាមផ្លូវមានប្រុសដទៃដោយយោងតាមហាទីសណាពីបានមានប្រសាសន៍ថា មានន័យថា «**នៅពេលណាស្ត្រីប្រើគ្រឿងក្រអូប ហើយនាងដើរកាត់បុរសមួយក្រុម ពួកគេស្រង់ក្លិនរបស់នាង គឺនាងអ៊ីចេះអ៊ីចោះមួយ មានន័យ ហ្ស៊ីណា(ផិត)**»។(អាពូទើវ៉ូទ)

# សឡាត

អាហ្សាននិងអ៊ីកម៉ះជាហ្វារហ្ឌូគីហ្វាយ៉ះចំពោះបុរសដែលនៅក្នុងភូមិ ហើយសូណាត់សម្រាប់អ្នកសឡាតម្នាក់ឯង និងអ្នកធ្វើដំណើរ ហើយម៉ឹករ៉ូសចំពោះស្ត្រី។ គេមិនអនុញ្ញាតឱ្យអាហ្សានមុនម៉ោងសឡាតទេ លើកលែងតែអាហ្សានសឡាតសូពុះ គេអនុញ្ញាតឱ្យអាហ្សានមុនម៉ោងបន្ទាប់ពីពាក់កណ្តាលយប់។

លក្ខខណ្ឌសឡាត :

១. ឥស្លាម ២.មានប្រាជ្ញា ៣.ដឹងក្តី ៤.មានទឹកវូហ្ឌុក ៥.ដល់ម៉ោងសឡាត។

ពេលហ្ស៊ូហួរ: ពេលហ្ស៊ូហួរចាប់ផ្តើមពីថ្ងៃទ្រេតចេញ រហូតដល់ស្រមោលអ្វីមួយស្មើនឹងខ្លួនឯង។

ពេលអាសើរ: ពេលដែលល្អបំផុត គឺស្រមោលអ្វីស្មើនឹងខ្លួនឯងពីរដង ហើយពេលដែលចាំបាច់រហូតដល់ថ្ងៃលិច។

ពេលសឡាតម៉ាគ្រិប: ពេលសឡាតម៉ាគ្រិបរហូតដល់ជើងមេឃក្រហមលិចបាត់។

ពេលសឡាតអ៊ីស្សា: ពេលដែលប្រសើរបំផុតគឺពាក់កណ្តាលអាធ្រាត ហើយពេលដែលចាំបាច់គឺរហូតដល់ទៀបភ្លឺ។ បន្ទាប់មកទៀតពេលសឡាតស៊ូហ្ពោះគឺរហូតដល់ថ្ងៃរះ។

៦.បិតបាំងកេរ្តិ៍ខ្មាស ៧. សម្អាតខ្លួន សម្លៀកបំពាក់ និងទីកន្លែងសឡាតតាមលទ្ធភាព ៨.បែរតម្រង់ទៅរកកិបឡ័តតាមលទ្ធភាពដែលអាចធ្វើបាន ៩.ការនៀត។

រូកុនសឡាតមាន១៤:

១.ឈរតាមលទ្ធភាពក្នុងសឡាតហ្វារហ្ឌូ។ ២.តឹកពៀរ៉តុលអៀហ្វ្រ៉ម។ ៣.សូត្រហ្វាទីហះ។ ៤.រូកុគ្រប់រ៉ឹកអាត់។ ៥.ងើបពីរូកុ។ ៦.ឈរឱ្យត្រង់ខ្លួនបន្ទាប់ងើបពីរូកុ។ ៧.ស៊ូជោតលើអវយវៈទាំងប្រាំពីរ។ ៨.អង្គុយចន្លោះស៊ូជោតទាំងពីរ។ ៩.សូត្រតាស្សះហ៊ុឌចុងក្រោយ។ ១០.អង្គុយតាស្សះហ៊ុឌ។ ១១.សឡាវ៉ាតចំពោះណាពីក្នុងតាស្សះហ៊ុឌចុងក្រោយ។ ១២.ឱ្យសាឡាមលើកទីមួយ។ ១៣.គ្រប់រូកុនទាំងអស់ត្រូវមានភាពនឹងនរ។ ១៤.ធ្វើតាមលំដាប់លំដោយ។

នេះជារូកុន ហើយសឡាតនីមួយៗមិនអាចត្រឹមត្រូវដាច់ខាត បើគ្មានវា ហើយរ៉ឹកអាត់ដែលគ្មានរូកុនណាមួយនៃរូកុនខាងលើ គឺគេចាត់ទុកជាមោឃៈ ទោះដោយចេតនា ឬដោយភ្លេចភ្លាំង។

កាតព្វកិច្ចសឡាតមានប្រាំបី :

១. គ្រប់តឹកពៀរទាំងអស់លើកលែងតែតឹកពៀរចាប់ផ្តើម ឬតឹកពៀរ៉តុលអៀសរ៉ម។ ២. សូត្រ «سمع الله لمن حمده» (សើមីអល់ឡរហ៊ូ លីម៉ាន់ហាមីដះ) ទាំងអ៊ីមាំ




និងម៉ាក់មុំ។ ៣. សូត្រ «ربنا ولك الحمد» (រ៉ប់តើណាវ៉ាឡើកើលហាំ) នៅពេលងើបពីរូកុ។ ៤. សូត្រ «سبحان ربي العظيم» (ស៊ុបហាណារ៉ប់ពីយ៉ាលអាហ្សីម) ម្តងគត់នៅពេលរូកុ។ ៥. សូត្រ «سبحان ربي الأعلى» (ស៊ុបហាណារ៉ប់ពីយ៉ាលអាក់ឡើ) តែម្តងគត់នៅពេលស៊ូជោត។ ៦. សូត្រ «رب اغفرلي» (រ៉ប់ពីគហ្វៀរលី) នៅចន្លោះស៊ូជោតទាំងពីរ។ ៧.សូត្រតាហ្សះហ៊ុតទីមួយ។ ៨.អង្គុយតាហ្សះហ៊ុត។

**<u>បើសិនជាបោះបង់កាតព្វកិច្ចណាមួយនៃកាតព្វកិច្ចទាំងនេះ ដោយចិត្តចង់គឺសឡាតរបស់គេក្លាយជាមោឃៈ តែបើបោះបង់ដោយភ្លេចភ្លាំងគឺត្រូវស៊ូជោតសះវី។</u>**

**<u>សូណាត់សឡាត៖</u>** ពាក្យសម្តី និងកាយវិការ។ **សឡាតមិនក្លាយជាមោឃៈទេ ទោះបីជាបោះបង់ប្រការស៊ូណាត់ណាមួយដោយចិត្តចង់។**

សូណាត់ពាក្យសម្តីមាន៖ សូត្រទូអាអិសទិហ្វតះ។ សូត្រអាអូហ្សូពីលឡោះ។ សូត្រពិសមិលឡះ។ សូត្រអាមីន ត្រូវសូត្រឮក្នុងសឡាតសូត្រឮ។ សូត្រសូរ៉ោះបន្ទាប់ពីសូត្រហ្វាទីហះរួច។ អ៊ីមាំត្រូវសូត្រឮខ្លាំង(ម៉ាក់មុំគេហាមសូត្រឮ)។ ចំពោះអ្នកសឡាតម្នាក់ឯងអាចសូត្រឮក៏បានមិនសូត្រឮក៏បាន)។ បន្ទាប់ពីសូត្រ (ربنا ولك الحمد) ម៉ាក់មុំអាចសូត្រថា «.. ملء السموات ..الخ»។ អាចសូត្របន្ថែមលើសពីមួយដងនៅពេលសូត្រ តើសពេស រូកុក និងស៊ូជោត និងសូត្រ (رب اغفرلي) ចន្លោះស៊ូជោតទាំងពីរ។

**<u>សូណាត់កាយវិការមាន:</u>** លើកដៃទាំងពីរជាមួយនឹងតឹកពៀរ៉តុលអៀសរ៉ម និងពេលរូកុ និងពេលងើបពីរូកុវិញនិងនៅពេលងើបពីតាស្សះហ៊ុឌទីមួយ ឱបដៃស្តាំលើដៃឆ្វេង ដាក់លើផ្ចិតនៅពេលឈរ។ ត្រូវសម្លឹងមើលត្រង់កន្លែងស៊ូជោត ឈរដោយដាក់ជើងទាំងពីរឃ្លាតចេញគ្នា។ ផ្តើមស៊ូជោតដោយដាក់ជង្គង់ទាំងពីរមុនបន្ទាប់មកដាក់ដៃ បន្ទាប់មកទៀតដាក់ថ្ងាសនិងច្រមុះ។ បើកស្លាបដៃទាំងពីរឱ្យចេញពីដងខ្លួន លើកពោះឱ្យផុតពីភ្លៅទាំងពីរ ហើយលើកភ្លៅទាំងពីរឱ្យផុតពីកំភួនជើង។ ដាក់ជង្គង់ទាំងពីរឱ្យឃ្លាតពីគ្នា។ បញ្ឈរបាតជើងទាំងពីរឱ្យឃ្លាតពីគ្នា។ ដាក់បាតម្រាមជើងទល់នឹងដី។ ដាក់ដៃទាំងពីរស្មើនឹងស្មាទាំងពីរ លាបាតដៃដាក់ជាប់នឹងដី ហើយផ្តុំម្រាមដៃ។ ក្រោកឈរដោយពឹងលើកម្លាំងបាតជើងខាងមុខ និងយកដៃទាំងពីរច្រត់នឹងក្បាលជង្គង់ទាំងពីរ។ អង្គុយយកជើងទ្រាប់គូថនៅចន្លោះស៊ូជោតទាំងពីរនៅពេលអង្គុយសូត្រតាស្សះហ៊ុឌទីមួយ ហើងអង្គុយគូថដល់ដីក្នុងតាស្សះហ៊ុឌទីពីរ។ ដាក់ដៃទាំងពីរលើភ្លៅទាំងពីរដោយលានិងផ្តុំម្រាមដៃទាំងពីរចន្លោះស៊ូជោតទាំងពីរ។ ក៏ដូចគ្នាផងដែរនៅពេលតាស្សះហ៊ុឌ គ្រាន់តែដៃស្តាំ ត្រូវក្តាប់កូនដៃ និងដៃនាង ហើយដាក់មេដៃទល់នឹងដៃកណ្តាលរាងជារង្វង់ ហើយកម្រើកម្រាមដៃចង្អុលនៅពេលហ្សីកៀរ និងទូអាចំពោះអល់





ឡោះ ជាសញ្ញាបង្ហាញអល់ឡោះជាម្ចាស់តែមួយ ហើយងាកស្តាំឆ្វេងនៅពេលឱ្យសាឡាម ត្រូវងាកទៅខាងស្តាំមុន។

**ស៊ូជោតសះវី** : សូណាត់ឱ្យស៊ូជោតសះវីនៅពេលសូត្រពាក្យណាមួយដែលស្រប ច្បាប់តែសូត្រខុសកន្លែងដោយការភ្លេច ដូចជាសូត្រគួរអានក្នុងស៊ូជោត។ គេអនុញ្ញាតឱ្យស៊ូជោតដែរ នៅពេលបោះបង់ប្រការសូណាត់។ ម្យ៉ាងទៀតចាំបាច់ត្រូវតែស៊ូជោត នៅពេលរូកុលើស ឬស៊ូជោតលើស ឬឈរលើស ឬអង្គុយលើស ឬក៏ឱ្យសាឡាមមុនសឡាតចប់។ ឬសូត្រខុសសំដែងនាំឱ្យល្អៀងន័យ ឬបោះបង់ប្រការចាំបាច់ ឬសង្ស័យថាលើសក្នុងពេលកំពុងប្រតិបត្តិនោះ។ លើសពីនេះ សឡាតក្លាយជាមោឃៈ បើសិនជាបោះបង់ស៊ូជោតសះវីដែលវ៉ាជិបដោយចិត្តចង់ ឬដោយចេតនា។ ស៊ូជោតសះវីពីរដងមុននឹងសាឡាម ឬបន្ទាប់ពីសាឡាមរួច។ តែបើសិនជាគេភ្លេចស៊ូជោតមានចន្លោះពេលយូរ គឺមិនចាំបាច់ស៊ូជោតទេ។

**របៀបសឡាត:** ពេលឈរសឡាតត្រូវតែតម្រង់ឆ្ពោះទៅកាន់គិបឡាត់រួចពោលថា «الله أكبر» អ៊ីមាំត្រូវសូត្រឱ្យឮ ហើយតឹកពៀរដទៃទៀតក៏ដូចគ្នាដែរដើម្បីឱ្យអ្នកខាងក្រោយស្តាប់ឮ ហើយម៉ាក់មុំត្រូវសូត្រតិចៗ។ នៅពេលតឹកពៀរ ត្រូវលើកដៃទាំងពីរឱ្យស្មើនឹងស្មាទាំងពីរ។ ក្រោយមកដាក់ដៃទាំងពីរចុះ ហើយឱបដៃស្តាំលើដៃឆ្វេង ហើយត្រូវដាក់ដៃទាំងពីរនៅលើផ្ចិតក្រោមទ្រូង។ ភ្នែកត្រូវសម្លឹងមើលទៅកាន់កន្លែងស៊ូជោត។ បន្ទាប់មក ត្រូវសូត្រទូអាអិសទីហ្វតះតាមរីវ៉ាយ៉ាត់ដែលមានក្នុងសុណ្ណះ ដូចជា :«سُبْحَانَكَ اللَّهُمَّ وَ بِحَمْدِكَ، وَتَبَارَكَ اسْمُكَ، وَتَعَالَى جَدُّكَ وَلاَ إِلَهَ غَيْرُكَ»

**(ស៊ុបហាណាកល់ឡហ៊ុម៉ា វ៉ាប៊ីហាំ ទីកា វ៉ាតាពើរ៉ាកាសម៉ូកា វ៉ាតាអាឡើ ជើទទូកា វ៉ាឡើអ៊ីឡើហើ ហ្គុយរ៉ូកា)**

ក្រោយមកសូត្រអាអ៊ូហ្សូពិលឡះ «أعوذ بالله» បន្ទាប់មកទៀតសូត្រពិសមិលឡះ «بسم الله» **(ប្រការទាំងអស់ខាងលើមិនត្រូវសូត្រឮទេ)**។ បន្ទាប់មកទៀតសូត្រហ្វាទីហះ ហើយសូណាត់ឱ្យម៉ាក់មុំសូត្រវានៅពេលដែលអ៊ីមាំនៅស្ងៀម តែមិនត្រូវសូត្រឮៗបើសិនជាសឡាតនោះជាសឡាតសូត្រឮ។ តែវ៉ាជិបចាំបាច់ត្រូវសូត្រហ្វាទីហះ នៅពេលណាសឡាតនោះជាសឡាតសូត្រតិចៗ។ បន្ទាប់មក គេត្រូវសូត្រនូវអ្វីដែលងាយស្រួលនៃគម្ពីរគួរអាន។ សឡាតសូហ្គោះសូណាត់ឱ្យសូត្រសូរ៉ោះវែងៗ និងសូត្រសូរ៉ោះខ្លីៗនៅពេលសឡាតម៉ាហ្គ្រិប ហើយសូត្រសូរ៉ោះវែងមធ្យមក្នុងសឡាតដទៃទៀត។ សូរ៉ោះវែងចាប់ពី សូរ៉ោះកហ្វ «سورة ق» រហូតដល់សូរ៉ោះអាំម៉ា «سورة عم»។ សូរ៉ោះមធ្យមចាប់ពីសូរ៉ោះ «سورة عم» រហូតដល់សូរ៉ោះអាត់ឌូហា «سورةالضحى» ។ សូរ៉ោះខ្លីចាប់ពីសូរ៉ោះទូហា «سورةالضحى» រហូតដល់សូរ៉ោះអាន់ណើស «سورةالناس»។ អ៊ីមាំ



ត្រូវសូត្រឮក្នុងសឡាតសូហ្គោះ ពីររឹកអាត់ដំបូងនៃសឡាតម៉ាហ្គ្រិប និងអ៊ីសា ហើយក្រៅពីនេះត្រូវសូត្រតិចៗ។ បន្ទាប់មក តឹកពៀរ និងរូកុ ហើយលើកដៃទាំងពីរ ដូចពេលលើកដៃតឹកពៀរ៉ទុលអៀសរ៉មដែរ។ ច្រត់ដៃទាំងពីរលើក្បាលជង្គង់ទាំងពីរ ហើយត្រូវញែកម្រាមដៃរបស់គេ ដាក់ខ្នងឱ្យស្មើ ហើយត្រូវដាក់ក្បាលឱ្យស្មើខ្នង រួច សូត្រថា «سبحان ربي العظيم» **(ស៊ុបហាណារ៉ប់ពីយ៉ាលអាហ្សុីម)** ចំនួនបីដង។ ងើបពីរូកុហើយសូត្រថា «سمع الله لمن حمده» **(សើមីអល់ឡរហ៊ូ លីម៉ាន់ហាមីដះ)** ។ ត្រូវលើកដៃទាំងពីរដូចការលើកដៃនៅពេលតឹកពៀរ៉ទុលអៀសរ៉មដែរ។ នៅពេលឈរត្រង់ត្រូវសូត្រថា

«رَبَّنَا وَلَكَ الْحَمْدُ حَمْدًا كَثِيْرًا طَيِّبًا مُبَارَكًا فِيْهِ مِلْءَ السَّمَوَاتِ وَمِلْءَ الْأَرْضِ وَمِلْءَ مَا شِئْتَ مِنْ شَيْءٍ بَعْدُ»

ក្រោយមកឱនស៊ូជោតព្រមជាមួយនឹងតឹកពៀរ ដាក់ស្លាបដៃទាំងពីរឱ្យឃ្លាតពីដងខ្លួន លើកពោះឱ្យផុតពីភ្លៅទាំងពីររបស់គេ ហើយដាក់ដៃទាំងពីរឱ្យស្មើនឹងស្មាទាំងពីរ។ ចុងម្រាមជើងទាំងពីរ និងម្រាមដៃត្រូវដាក់តម្រង់ឆ្ពោះទៅកាន់គិបឡ៉ត។ រួចសូត្រ «سُبْحَانَ رَبِّيَ الْأَعْلَى» **(ស៊ុបហាណារ៉ប់ពីយ៉ាលអាក់ឡើ)** ចំនួនបីដង។ គេអាចសូត្របន្ថែមនូវអ្វីដែលមានរីវ៉ាយ៉ាត់ក្នុងហាទីស ឬទូអាតាមអ្វីដែលគេចង់។ ក្រោយមកងើបឡើងវិញព្រមជាមួយតឹកពៀរ ហើយអង្គុយយកជើងឆ្វេងទ្រាប់គូថ និងបញ្ឈរបាតជើងស្តាំហើយបត់ម្រាមជើងសំដៅទៅកាន់គិបឡ័ត ដាក់ម្រាមដៃតម្រង់ឆ្ពោះទៅគិបឡ័ត ឬបញ្ឈរបាតជើងទាំងពីរ និងបត់ម្រាមជើងបែរឆ្ពោះទៅគិបឡ័ត ហើយអង្គុយលើកែងជើងទាំងពីរ រួចសូត្រ «رَبِّ اغْفِرْ لِيْ» **(រ៉ប់ពីគហ្វៀរលី)** ចំនួនពីរដង។ គេអាចសូត្របន្ថែមថា

«وَارْحَمْنِيْ وَاجْبُرْنِيْ وَارْفَعْنِيْ وَارْزُقْنِيْ وَانْصُرْنِيْ وَاهْدِنِيْ وَعَافِنِيْ وَاعْفُ عَنِّيْ»

ក្រោយមកស៊ូជោតលើកទីពីរដូចស៊ូជោតលើកទីមួយដែរ។ រួចងើបឡើងព្រមជាមួយនឹងតឹកពៀរ ក្រោកឈរដោយពឹងលើចុងម្រាមជើង ហើយសឡាតរឹកអាត់ទីពីរដូចរឹកអាត់ទីមួយដែរ។ លុះចប់រឹកអាត់ទាំងពីរហើយ អង្គុយតាស្សះហ៊ុឌគឺដាក់គូថផ្ទាល់នឹងដី ដាក់ដៃឆ្វេងលើភ្លៅខាងឆ្វេង និងដៃស្តាំលើភ្លៅខាងស្តាំ ហើយក្តាប់កូនដៃ និងដៃនាង ដាក់មេដៃ និងម្រាមកណ្តាលគងគ្នាជារង្វង់ ហើយកម្រើកម្រាមចង្អុល និងសូត្រថា

«اَلتَّحِيَّاتُ لِلَّهِ وَالصَّلَوَاتُ وَالطَّيِّبَاتُ، السَّلَامُ عَلَيْكَ أَيُّهَا النَّبِيُّ وَرَحْمَةُ اللهِ وَبَرَكَاتُهُ , السَّلَامُ عَلَيْنَا وَعَلَى عِبَادِ اللهِ الصَّالِحِيْنَ, أَشْهَدُأَنْ لاَ إِلَهَ إِلاَّ اللهُ , وَأَشْهَدُ أَنَّ مُحَمَّدًا عَبْدُهُ وَرَسُوْلُهُ »

អាត់តាហ៊ីយ៉ាតូលីលឡើហ វ៉ាសហ្សរឡើវ៉ាតូ វ៉ាតតុយយីពើត អាសសាឡាម៉ូអាឡៃកើ អៃយូហាន់ណាពីយូ វ៉ារ៉ោះម៉ាតុលឡរហ៊ី វ៉ាពើរ៉ាកើទុះ អាសសាឡា ម៉ូអា




ឡៃណា វ៉ាអាឡៃ អ៊ីពើទីលឡើហ៊ីសហ្សរលីហ៊ីន អាស់ហើទូ អាលឡើអ៊ីឡៃ ហើអ៊ីលលុលឡោះ វ៉ាអាស់ហើទូ អាន់ណាម៉ូហាំម៉ាទាន់ អាប់ទូហ៊ូ វ៉ារ៉សូលុះ។
បន្ទាប់ពីសូត្ររួចត្រូវក្រោកឈរសឡាតបន្តទៀតចំពោះសឡាតបីរឹកអាត់ និងសឡាតបួនរឹកអាត់ព្រមជាមួយតឹកពៀរ និងលើកដៃទាំងពីរ។ បន្តសឡាតរឹកអាត់ដែលនៅសល់។ ក៏ប៉ុន្តែមិនត្រូវសូត្រឮទេ។ សូត្រត្រឹមតែហ្វាទីហះប៉ុណ្ណោះ។ រួចហើយអង្គុយតាហ្សះហ៊ុឌចុងក្រោយ គឺដាក់គូថផ្ទាល់នឹងដី ផ្តេកជើងឆ្វេងក្រោមជើងស្តាំ ហើយបញ្ឈរបាតជើងស្តាំ។ ដាក់គូថផ្ទាល់នឹងដី (អង្គុយគូថផ្ទាល់ដីសម្រាប់តែសឡាតណាដែលមានតាហ្សះហ៊ុឌពីរដងតែប៉ុណ្ណោះ)។ គេត្រូវសូត្រតាហ្សះហ៊ុឌទី១ រួចហើយសូត្រថា

"اللَّهُمَّ صَلِّ عَلَى مُحَمَّدٍ، وَعَلَى آلِ مُحَمَّدٍ كَمَا صَلَّيْتَ عَلَى إِبْرَاهِيْمَ، وَعَلَى آلِ إِبْرَاهِيْمَ إِنَّكَ حَمِيْدٌ مَجِيْدٌ، اللَّهُمَّ بَارِكْ عَلَى مُحَمَّدٍ وَعَلَى آلِ مُحَمَّدٍ، كَمَا بَارَكْتَ عَلَى إِبْرَاهِيْمَ، وَعَلَى آلِ إِبْرَاهِيْمَ إِنَّكَ حَمِيْدٌ مَجِيْدٌ".

អល់ឡហ៊ុំម៉ា សល់លី អាលើ ម៉ូហាំម៉ាត់ វ៉ាអាលើ អាលី ម៉ូហាំម៉ាត់ កើម៉ា សល់ឡៃតា អាលើ អ៊ីព្រ៉ហ៊ីម វ៉ាអាលើ អាលី អ៊ីព្រ៉ហ៊ីម អ៊ីនណាកើ ហាមីទុំ ម៉ាជីទ អល់ឡោះហុំម៉ាពើរិក អាលើ ម៉ូហាំម៉ាត់ វ៉ាអាលើ អាលី ម៉ូហាំម៉ាត់ កើម៉ា
ពើរឹកតា អាលើ អ៊ីព្រ៉ ហ៊ីម វ៉ាអាលើ អាលី អ៊ីព្រ៉ហ៊ីម អ៊ីនណាកើ ហាមីទុំ ម៉ាជីទ។
ហើយសូណាត់ឱ្យសូត្រថា

"أَعُوْذُ بِاللهِ مِنْ عَذَابِ النَّارِ، وَمِنْ عَذَابِ الْقَبْرِ، وَمِنْ فِتْنَةِ الْمَحْيَا وَالْمَمَاتِ، وَمِنْ فِتْنَةِ الْمَسِيْحِ الدَّجَّالِ"

និងមានទូអាផ្សេងៗទៀតដែលមានរីវ៉ាយ៉ាត់ក្នុងហាទីស បន្ទាប់មកឱ្យសាឡាមចំនួនពីរដង។ បែរទៅខាងស្តាំដោយសូត្រថា៖«السَّلاَمُ عَلَيْكُمْ وَرَحْمَةُ اللهِ» **(អាសសាឡាម៉ូអាឡៃគុំវ៉ារ៉សម៉ាតុលឡហ៍)** រួចហើយបែរទៅខាង
ឆ្វេង។តាមសុណ្ណះ ឱ្យសូត្រទូអាក្រោយសឡាតដែលមានរីវ៉ាយ៉ាត់ក្នុងហាទីស[1]។

---

[1] សូត្រ(أستغفر الله) **(អាស់តោកហ្វិរុលឡោះ)**ចំនួនបីដង។ សូត្រ
(اللّٰهُمَّ أنت السلام ومنك السلام تباركت ياذا الجلال والإكرام)
**(អល់ឡោះហុំម៉ាអាន់តាសសាឡាមវ៉ាមីនកាសសាឡាមតាប៉ោរឹកតាយ៉ាហ្សាលជើឡើលីវ៉ាល់អ៊ីករ៉ម)**១ដង។ សូត្រ
(لا إله إلا الله وحده لا شريك له له الملك وله الحمد وهو على كل شيء قدير لا حول ولا قوة إلا بالله لا إله إلا الله ولا نعبد إلا إياه له النعمة وله الفضل وله الثناء الحسن ؛ لا إله إلا الله مخلصين له الدين ولو كره الكافرون،اللّٰهُمَّ لا مانع لماأعطيت ولامعطي لما منعت ، ولا ينفع ذا الجد منك الجد)
ឡាអ៊ីឡាហើអ៊ីលលុលឡោះហ្វះឡើហូឡាសើរីកើឡះ ឡាហ៊ូលមុលគូវ៉ាឡាហ៊ូលហាំទូ វ៉ាហូវ៉ាអាឡាគុលលីសៃអ៊ីនក៏ឡើរ ឡាហៅឡាវ៉ាឡាគូវ៉ាតាអ៊ីលឡាពីលឡះ



**សឡាតអ្នកជំងឺ៖** បើសិនការឈរធ្វើឱ្យឈឺកាន់តែធ្ងន់ ឬគ្មានលទ្ធភាពឈរ គឺសឡាតអង្គុយ បើអត់លទ្ធភាព សឡាតដេកផ្អៀងខ្លួន ហើយបើពិបាកទៀត អាចសឡាតដេកផ្ងារ ។ បើសិនជាគ្មានលទ្ធភាពរ៉ូកុ និងស៊ូជោត អាចធ្វើសញ្ញាដោកក្បាល ហើយគេត្រូវសឡាតសងវិញ ចំពោះសឡាតណាដែលគេខានមិនបានប្រតិបត្តិ។ តែបើសិនជាគេសឡាតទៅតាមពេលកំណត់មានការលំបាកចំពោះគេ ចូរឱ្យគេសឡាតរួមគ្នារវាងហ្សូហួរនិងអាសើរ ម៉ាហ្គ្រិបនិងអ៊ីសារ ក្នុងពេលណាមួយក៏បានក្នុងពេលសឡាតទាំងពីរនោះ។

**សឡាតអ្នកដំណើរ៖** បើរយៈចម្ងាយដំណើររបស់គាត់មានប្រវែងលើសខ្វះប្រហែល៨០ គ.ម៉នោះគេអនុញ្ញាត។ ចំពោះសឡាតបួនរឹកអាត់គេអាចសឡាតកសើរត្រឹមតែពីររឹកអាត់។ តែបើសិនជាគេប្រាថ្នាចង់ស្នាក់នៅកន្លែងណាមួយក្នុងពេលកំពុងធ្វើដំណើរលើសពីបួនថ្ងៃ (ស្មើនឹង២០ហ្វើរទូ) គេត្រូវសឡាតពេញវិញដូចធម្មតាតាំងពីពេលដែលគេទៅដល់ ហើយមិនត្រូវសឡាតកសើរទៀតទេ។ បើសិនជាអ្នកដំណើរសឡាតពេលស្នាក់នៅក្នុងភូមិ ឬក៏ភ្លេចសឡាតពេលនៅក្នុងភូមិ

---

ឡាអ៊ីឡាហើអ៊ីលលុលឡោះ វ៉ាឡាណាក់ពូទូអ៊ីលឡាអ៊ីយ៉ាហូ ឡាហូនណែកម៉ាតូ វ៉ាឡាហ៊ុលហ្វទល៏ វ៉ាឡាហ៊ូសសាណាក់អ៊ូលហូសណា ឡាអ៊ីឡាហើអ៊ីលលុលឡោះហើមូខលីស៊ីនណោឡាហ៊ុទទីន វ៉ាលៅគើរីហាលគើហ៊្វីរូន អល់ឡោះហុំម៉ាឡាម៉ាណិអាលីម៉ាអាក់តុយតា វ៉ាឡាម៉ូកតីយ៉ាលីម៉ាម៉ាណាក់តា វ៉ាឡាយ៉ានហ្វាអ៊ុលហ្សាលជីទទីមីនកាលជីទ។ បន្ទាប់ពីសឡាតហ្វាចើរ និងសឡាតម៉ាហ្គ្រិប សូត្រហ្សិកៀរខាងលើជាមួយនឹងការសូត្រ

(لا إله إلا الله وحده لا شريك له له الملك وله الحمد يحي ويميت وهو على كل شيء قدير)
**(ឡាអ៊ីឡាហើអ៊ីលលុលឡោះហ្វាវ៉ះទើហ្វូឡាសើរីកើឡះ ឡាហ៊ូលមុលគូវ៉ាឡាហ៊ូលហាំទូ យ៉ូសយ៉ីវ៉ាយ៉ូមីតូ វ៉ាហ៊ូវ៉ាអាឡាគុលលីសៃអ៊ីនក៏ទ្បើរ)** ចំនួន១០ដង។ បន្ទាប់មក សូត្រ (سبحان الله) (ស៊ុបហាណុលឡោះ) ចំនួន៣៣ដង។ (الحمد لله) **(អាល់ហាំទូលីលឡះ)** ចំនួន៣៣ដង។ (الله أكبر) (អល់ឡោះហូអឹកពើរ)ចំនួន៣៣ដង។ សូត្របង្គ្រប់មួយរយដោយ (لا إله إلا الله وحده لا شريك له له الملك وله الحمد وهو على كل شيء قدير) **(ឡាអ៊ីឡាហើអ៊ីលលុលឡោះហ្វាវ៉ះទើហ្វូឡាសើរីកើឡះ ឡាហ៊ូលមុលគូវ៉ាឡាហ៊ូលហាំទូ វ៉ាហ៊ូវ៉ាអាឡាគុលលីសៃអ៊ីនក៏ទ្បើរ)**។ រួចហើយសូត្រ (آية الكرسي) សូរ៉ោះបាកោរ៉ោះ អាយ៉ាត់លេខ២៥៥។ សូត្រ (قل هو الله أحد) **(គុលហ៊ូវ៉ុលឡោះហូអាហាទ)**។ សូត្រ (قل أعوذ برب الفلق) **(គុលអាអ៊ូហ្សូពីរ៉ាប់ពិលហ្វាលុក)** និងសូត្រ (قل أعوذ برب الناس) **(គុលអាអ៊ូហ្សូពីរ៉ាប់ពិនណាស)** ហើយត្រូវសូត្រ ទាំងបីនេះចំនួនបីដងបន្ទាប់ពីសឡាត ហ្វាចើរ និងសឡាតម៉ាហ្គ្រិប។

ហើយស្រាប់តែនឹកឃើញវិញក្នុងពេលកំពុងធ្វើដំណើរ ឬផ្ទុយមកវិញគឺ គេសឡាតបង្គ្រប់វិញនូវអ្វីដែលគេខកខាន។ សម្រាប់អ្នកដំណើរអាចសឡាតពេញបាន តែបើគេសឡាតកសើរជាការប្រសើរជាង។

**សឡាតជំអាត់៖** ប្រសើរជាងសឡាតហ្វូហ្ទរ។ ជាសឡាតមួយឯករាជ្យពីសឡាតហ្វូហ្ទរ។ វាពុំមែនជាសឡាតកសើរហ្វូហ្ទរ ហើយគេមិនអនុញ្ញាតឱ្យសឡាតបួនរឹកអាត់នោះទេ។ មិនពាក់ព័ន្ធជាមួយនឹងណៀតសឡាតហ្វូហ្ទរ។ គេមិនអនុញ្ញាតឱ្យសឡាតជំអាត់រួមជាមួយនឹងសឡាតអាសើរដែរ ទោះបីជាមានមូលហេតុត្រូវសឡាតរួមក៏ដោយ។

**សឡាតវីតៀរ៖** ជាសុណ្ណះ។ **ពេលវេលារបស់វា៖** ចាប់ពីសឡាតអ៊ីសារហេូតដល់ទៀបភ្លឺ។ **តិចបំផុត៖** មួយរឹកអាត់ ហើយច្រើនបំផុត ដប់មួយរឹកអាត់។ បើសឡាតពីររ៉ក់អាត់ឱ្យសាឡាមម្ដងជាការប្រសើរ។ ឬអាចសឡាតបួន ឬប្រាំមួយ ឬប្រាំបីរួមគ្នាតែម្ដង។ រួចសឡាតមួយរឹកអាត់បបន្ទាប់ពីសឡាតចំនួនគូ។ ឬអាចសឡាតបី ឬប្រាំ ឬប្រាំពីរ ឬប្រាំបួន ហើយសឡាតវីតៀរពេញលេញដែលតិចគឺបីរឹកអាត់ ពីរសាឡាម។ មានរីវ៉ាយ៉ាត់ថា បន្ទាប់ពីវីតៀររួច សឡាតពីររឹកអាត់អង្គុយ។

**សឡាតម៉ាយិត៖** ផ្ងូតទឹកសពអ្នកមូស្លីម រុំសព សឡាតឱ្យសព សែងសព បញ្ចុះសព គឺជាហ្វារទូគីហ្វាយ៉ះ។ លើកលែងអ្នកដែលស្លាប់ស្ហាហ៊ីតគេមិនត្រូវមុជទឹកឱ្យ មិនរុំសព គេអនុញ្ញាតឱ្យសឡាត ហើយគេបញ្ចុះទាំងក្នុងសភាពដែលគេស្លាប់។ សម្រាប់បុរសគេរុំដោយប្រើក្រណាត់សចំនួនបីជាន់ ចំណែកឯស្ត្រីវិញចំនួនប្រាំជាន់ ក្រណាត់សំពត់ ក្រណាត់គ្របមុខ អាវ និងក្រណាត់រុំពីរជាន់។ សុណាត់សម្រាប់អ៊ីមាំ និងអ្នកសឡាតម្នាក់ឯងឈរនៅចំទ្រូងបុរស ហើយស្ត្រីឈរនៅចំពាក់កណ្ដាល។ រួចតឹកពៀរបួនដង រួមជាមួយនឹងការលើកដៃគ្រប់តឹកពៀរទាំងអស់។ តឹកពៀរលើកទីមួយ សូត្រអាអ៊ូហ៊្សពិលឡះ និងសូត្រពិសមិលឡះ ហើយសូត្រហ្វាទីហះតិចៗ។ បន្ទាប់មកតឹកពៀរលើកទីពីរ សូត្រសឡាវ៉ាតចំពោះណាពី។ បន្ទាប់មកទៀត តឹកពៀរលើកទីបី សុំទូអាឱ្យម៉ៃយិត(សព)។ ចុងបញ្ចប់តឹកពៀរលើកទីបួន ឈរស្ងៀមបន្តិច ហើយឱ្យសាឡាមដោយងាកទៅស្ដាំតែម្ដងគត់។ ហារ៉ាមលើកពូនផ្នូរឱ្យខ្ពស់ជាងមួយចំអាម ដាក់បង្គោល ឱបថើប អុចធូប សរសេរ ឬអង្គុយ ឬដើរលើផ្នូរ។ ហារ៉ាមដាក់អំពូលបំភ្លឺ និងដើរជុំវិញវា សាងសង់ម៉ាស្ជិតលើវា ឬបញ្ចុះសពនៅក្នុងម៉ាស្ជិត។ ចាំបាច់ត្រូវបំផ្លាញចោលនូវតួប៉មដែលគេសង់លើ។

❖ ពាក្យកាន់ទុក្ខគ្មានកំណត់នោះទេ៖ អ្នកខ្លះគេពោលនៅពេលកាន់ទុក្ខថា «أَعْظَمَ اللهُ أَجْرَكَ وَأَحْسَنَ عَزَاءَكَ وَغَفَرَ لِمَيِّتِكَ» មានន័យថា **«សូមឱ្យអល់ឡោះផ្ដល់ផល**



**បុណ្យរបស់អ្នកឱ្យកាន់តែច្រើន សូមឱ្យទ្រង់ប្រទានការស្រោកទុក្ខរបស់អ្នកឱ្យកាន់តែប្រសើរឡើង។ សូមឱ្យទ្រង់អភ័យទោសចំពោះមរណជនរបស់អ្នក»។**
ការកាន់ទុក្ខរបស់អ្នកមូស្លីមចំពោះអ្នកកាហ្វៀរ «أَعْظَمَ اللهُ أَجْرَكَ وَأَحْسَنَ عَزَاءَكَ» សូមឱ្យអល់ឡោះផ្តល់ផលបុណ្យរបស់អ្នកឱ្យកាន់តែច្រើន សូមឱ្យទ្រង់ប្រទានការស្រោកទុក្ខរបស់អ្នកឱ្យកាន់តែប្រសើរឡើង។ គេមិនអនុញ្ញាតឱ្យអ្នកកាហ្វៀរកាន់ទុក្ខអ្នកឥស្លាមទេ។

❖ **ចាំបាច់ចំពោះអ្នកដែលដឹងថា គ្រួសាររបស់គេទ្រហោយំនៅពេលដែលគេស្លាប់ដូច្នេះគេត្រូវផ្តែផ្តាំពួកគេឱ្យបោះបង់ បើពុំនោះទេ គេនឹងត្រូវទទួលទារុណកម្មដោយសារការទ្រហោយំរបស់ពួកគេ។**

❖ អ៊ីមាំស្សាហ្វីអ៊ីយ៍បាននិយាយថា ការអង្គុយជុំគ្នាកាន់ទុក្ខជាអំពើមឹករ៉ូស គឺក្រុមគ្រួសារអ្នកស្លាប់អង្គុយជុំគ្នានៅក្នុងផ្ទះចាំទទួលអ្នកដែលចង់មកចូលរួមកាន់ទុក្ខ។ តែល្អវាត្រូវបំបែកគ្នាទៅបំពេញការងាររៀងៗខ្លួន ទោះប្រុសក្តី ស្ត្រីក្តី។

❖ សូណាត់ឱ្យធ្វើម្ហូបអាហារឱ្យគ្រួសារអ្នកស្លាប់ទទួលទាន ហើយមឹករ៉ូសទទួលទានចំណីអាហាររបស់ពួកគេ ឬធ្វើចំណីអាហារសម្រាប់អ្នកដែលជួបជុំគ្នានៅផ្ទះរបស់គ្រួសារអ្នកស្លាប់។

❖ សូណាត់ឱ្យទៅហ្សីយ៉ារ៉ោះផ្នូរអ្នកមូស្លីម តែមែនធ្វើដំណើរឆ្ងាយទេ។ គេអនុញ្ញាតឱ្យទៅហ្សីយ៉ារ៉ោះផ្នូររបស់អ្នកកាហ្វៀរ ហើយគេមិនបានហាមអ្នកកាហ្វៀរទៅហ្សីយ៉ារ៉ោះផ្នូរអ្នកឥស្លាម។

❖ សូណាត់ចំពោះអ្នកដែលចូលទៅកន្លែងផ្នូរត្រូវទូអាថា

"السَّلَامُ عَلَيْكُمْ دَارَ قَوْمٍ مُؤْمِنِينَ - أو: أَهْلَ الدِيَارِ مِنَ الْمُؤْمِنِيْنَ - وَإِنَّا إِنْ شَاءَ اللَّهُ بِكُمْ لَلَاحِقُونَ، يَرْحَمُ اللهُ الْمُسْتَقْدِمِيْنَ مِنَّا وَالْمُسْتَأْخِرِيْنَ،نَسْأَلُ اللهَ لَنَا وَلَكُمُ الْعَافِيَةَ، اللَّهُمَّ لَا تَحْرِمْنَا أَجْرَهُمْ، وَلَا تَفْتِنَّا بَعْدَهُمْ وَاغْفِرْلَنَا وَلَهُمْ"

មានន័យថា«សូមសាឡាមកើតមានដល់អ្នកទាំងអស់គ្នាដែលនៅក្នុងផ្នូរនៃពួកអ្នកមានជំនឿ។ឬថា ម្ចាស់ផ្នូរនៃពួកអ្នកមានជំនឿ។ (إِنْ شَاءَ اللَّهُ) ពួកយើងខ្ញុំនឹងទៅតាមពួកអ្នក។ សូមអល់ឡោះអាណិតមេត្តាដល់អ្នកដែលបានស្លាប់មុន និងអ្នកដែលនឹងត្រូវស្លាប់ជាបន្តបន្ទាប់នោះក្នុងចំណោមពួកយើង។ យើងខ្ញុំបួងសួងសុំពីអល់ឡោះ សូមទ្រង់ប្រទានសេចក្តីសុខសប្បាយដល់យើងខ្ញុំ និងពួកអ្នក។ ឱអល់ឡោះជាម្ចាស់! សូមទ្រង់កុំហាមពួកយើងចំពោះផលបុណ្យរបស់ពួកគាត់ និងសូមទ្រង់កុំធ្វើឱ្យពួកយើងជួបប្រទះនឹងវិបត្តិបន្ទាប់ពីពួកគាត់។ សូមទ្រង់អភ័យទោសចំពោះពួកយើង និងពួកគាត់។

❖ ហារ៉ាមសរសេរអាយ៉ាត់គួរអានលើកាហ្វាន់ ខ្លាចក្រែងប្រលាក់ ពីព្រោះវាជាការប្រមាថគួរអាន ហើយគ្មានរីវ៉ាយ៉ាត់ពីណាពីឱ្យធ្វើដូច្នេះផងដែរ។
❖ ទូអាឱ្យអ្នកដែលស្លាប់៖ណាពីបានសុំទូអាឱ្យអ្នកដែលស្លាប់ថា
" اللَّهُمَّ اغْفِرْ لَهُ وَارْحَمْهُ، وَعَافِهِ ،وَاعْفُ عَنْهُ،وَأَكْرِمْ نُزُلَهُ ، وَوَسِّعْ مُدْخَلَهُ ، وَاغْسِلْهُ بِالْمَاءِ وَالثَّلْجِ وَالْبَرَدِ، وَنَقِّهِ مِنَ الْخَطَايَا كَمَا يُنَقَّى الثَّوْبُ الْأَبْيَضُ مِنَ الدَّنَسِ ، وَأَبْدِلْهُ دَاراً خَيْراً مِنْ دَارِهِ ، وَأَهْلاً خَيْراً مِنْ أَهْلِهِ وَزَوْجاً خَيْراً مِنْ زَوْجِهِ، وَأَدْخِلْهُ الْجَنَّةَ ،وَأَعِذْهُ مِنْ عَذَابِ الْقَبْرِ وَمِنْ عَذَابَ النَّارِ"
មានន័យថា«**ឱអល់ឡោះជាម្ចាស់! សូមទ្រង់មេត្តាអភ័យទោសចំពោះគាត់និងសណ្តោសប្រណីដល់គាត់។ឱអល់ឡោះ! សូមទ្រង់មេត្តាសសណ្តោសប្រណីចំពោះទោសកំហុស និងអភ័យទោសដល់គាត់នូវកំហុសទាំងឡាយ។ សូមទ្រង់លើកដំកើងចំពោះទីអាស្រ័យរបស់គាត់។ ហើយសូមទ្រង់ប្រទានភាពទូលាយក្នុងផ្នូររបស់គាត់ ហើយលាងសម្អាតគាត់នឹងទឹក ទឹកកក និងទឹកព្រិល។ សូមទ្រង់ជម្រះសម្អាតគាត់ឱ្យជ្រះស្អាតពីអំពើបាបទាំងឡាយដូចជាគេជម្រះសម្អាតក្រណាត់សពីភាពកខ្វក់។ សូមទ្រង់ផ្លាស់ប្តូរកន្លែងស្នាក់របស់គាត់ឱ្យល្អប្រសើរជាងនៅលោកីយ៍ និងគ្រួសារល្អជាងគ្រួសារគាត់ ព្រមទាំងប្រពន្ធល្អជាងប្រពន្ធរបស់គាត់។ ឱអល់ឡោះ! សូមទ្រង់មេត្តាឱ្យគាត់បានចូលឋានសួគ៌ និងបញ្ចៀសគាត់ពីទារុណកម្មក្នុងផ្នូរ និងទារុណកម្មនៃភ្លើងនរក**»។ (មូស្លីម)
សឡាតថ្ងៃរយ៉ាទាំងពីរ៖ សឡាតថ្ងៃរយ៉ាគឺជាហ្សារទូកីហ្សាយ៉ះ។ ពេលវេលាដូចគ្នានឹងជាពេលសឡាតទូហា។ បើសិនជាគេទើបនឹងដឹងថា ថ្ងៃរយ៉ាបន្ទាប់ពីថ្ងៃលិចរួចនោះ គេត្រូវសឡាតសងវិញនៅថ្ងៃស្អែក។ ហើយលក្ខខណ្ឌរបស់វាដូចនឹងសឡាតជុមអាត់ដែរខុសត្រង់យុតហ្ពះទាំងពីរ។ មឹករ៉ូសសឡាតសូណាត់មុននិងក្រោយនៅឯកន្លែងសឡាតថ្ងៃរយ៉ានោះ។ លក្ខណៈរបស់វាគឺសឡាតពីររឹកអាត់។ តឹកពៀរក្នុងរឹកអាត់ទី១ចំនួនប្រាំមួយដង បន្ទាប់ពីតឹកពៀររ៉ាតុលអៀសរ៉ម់និងមុនសូត្រអាអ៊ូហ្សូពិលឡះ។ ក្នុងរឹកអាត់ទី២ចំនួនប្រាំដង មុននឹងសូត្រ ត្រូវលើកដៃទាំងពីរនៅគ្រប់ពេលតឹកពៀរទាំងអស់។ រាល់តឹកពៀរនីមួយៗត្រូវសូត្រ(تحميد) និងសឡាវ៉ាតចំពោះណាពី។ បន្ទាប់មកសូត្រ អាអូហ្សូពីលឡះ និងសូត្រហ្វាទីហះឱ្យ៣។ ក្នុងរឹកអាត់ទី១សូត្រសូរ៉ោះសាប់ពីហ៊ុស«سورة سبح» និងរឹកអាត់ទី២សូត្រសូរ៉ោះអាល់ហ្គស្ស៊ីយ៉ះ «سورة الغاشية»។ នៅពេលសឡាតរួចត្រូវសូត្រពីរយុតហ្ពះដូចយុតហ្ពះជុមអាត់ដែរ។ តែសូណាត់ឱ្យសូត្រតឹកពៀរឱ្យបានច្រើននៅក្នុងយុតហ្ពះទាំងពីរនោះ។ បើសិនជាសឡាតនៅថ្ងៃរយ៉ាដូចសឡាតសូណាត់ក៏ត្រឹមត្រូវដែរ ពីព្រោះ ការតឹកពៀរលើស និងការហ្សុំកៀរចន្លោះតឹកពៀរទាំងពីរគឺជាសូណាត់។





**សទ្បាតសូរ្យគ្រាស ឬចន្ទគ្រាស៖** សទ្បាតសូរ្យគ្រាស ឬចន្ទគ្រាសគឺជាសុណ្ណះ។ ពេលវេលារបស់វាចាប់ពីពេលសូរ្យគ្រាស ឬចន្ទគ្រាសរហូតដល់លែងមាន។ គេមិនត្រូវសងវិញទេ បើសិនជាអស់ហេតុហើយនោះ។ សទ្បាតនេះមានពីររីកអាត់ សូត្រឮក្នុងរីកអាត់ទីមួយទាំងហ្វាទីហះ និងសូត្រសូរ៉ោះវែងៗ។ រួចរូកុឱ្យយូរ ហើយងើបមកវិញដោយសូត្រថា «سمع الله لمن حمده» **(សើមីអល់ឡោះហូលីម៉ាន់ហាមីដះ)**។ កុំទាន់ស៊ូជោត ត្រូវសូត្រហ្វាទីហះបន្ត និងសូត្រសូរ៉ោះវែង។ រួចរូកុឱ្យយូរ ហើយស៊ូជោតពីរដងឱ្យយូរ។ បន្ទាប់មក សទ្បាតរីកអាត់ទី២ធ្វើដូចរីកអាត់ទី១ដែរ។ បន្ទាប់មកសូត្រតាហ្យះហ៊ុឌ និងឱ្យសាឡាម។ បើសិនជាម៉ាក់មុំមកដល់ក្រោយពេលរូកុទី១គឺគេមិនទាន់មួយរីកអាត់នោះទេ។

**សទ្បាតសុំទឹកភ្លៀង៖** សូណាត់ឱ្យសទ្បាតនៅពេលដីស្ងួតហួតហែង ខ្វះទឹកភ្លៀង។ ពេលវេលា លក្ខណៈ និងច្បាប់របស់វាដូចសទ្បាតថ្ងៃរយ៉ាដែរ។ គ្រាន់តែខុសគ្នាត្រង់គេសូត្រយុតហ្គះតែម្តងប៉ុណ្ណោះ ក្រោយសទ្បាតរួច។ សូណាត់ឱ្យប្តូរសម្លៀកបំពាក់នៅចុងយុតហ្គះដើម្បីជាសេចក្តីសង្ឃឹមមួយនឹងបានផ្លាស់ប្តូរស្ថានភាព។

**សទ្បាតស៊ូណាត់៖** ពិតប្រាកដណាស់រ៉ស៊ូលុលឡោះលោកបានសទ្បាតជារៀងរាល់ថ្ងៃក្រៅអំពីសទ្បាតហ្វារឌូ(ដប់ពីររីកអាត់)គឺ: ពីររីកអាត់មុនពេលសទ្បាតស៊ូពោះ បួនរីកអាត់មុនពេលសទ្បាតស៊ូហ៊ូទ និងពីររីកអាត់ក្រោយអំពីវា ពីរីកអាត់ក្រោយសទ្បាតមោគ្រិប និងពីររីកអាត់ក្រោយសទ្បាតអ៊ីសា។ហើយនឹងមានការរាយការណ៍ផ្សេងពីនេះទៀតអំពីការសទ្បាតសូណាត់។

**ពេលវេលាដែលគេហាមឃាត់៖** ហារ៉មក្នុងការសទ្បាតស៊ូណាត់ ឬខ្លះៗអំពីវាក្នុងពេលវេលាដែលមានការហាមឃាត់មិនឱ្យសទ្បាតក្នុងវាឡើយ ដូចជា:

១/ ចាប់ពីពេលសីតរុណរះរហូតដល់ថ្ងៃរះមានកំពស់ប្រហែលប្រវែងលំពែង។

២/នៅពេលដែលថ្ងៃនៅចំកណ្តាលមេឃរហូតទាល់តែថ្ងៃជ្រេ។ ៣/បន្ទាប់ពីសទ្បាតអាសើររហូតដល់ថ្ងៃលិច។ ចំណែកអ្វីដែលមានមូលហេតុគឺអាចសទ្បាតបានក្នុងពេលវេលាទាំងនេះ ដូចជា: សទ្បាតតាហ៊ីយ៉ាតុលម៉ាស្ជិទ ពីររីកអាត់ក្រោយតវ៉ាហ្វ ស៊ូណាតស៊ូពោះ សទ្បាតឱ្យអ្នកស្លាប់ ពីររីកអាត់ក្រោយវ៉ូឌុ និងស៊ូជូទតីឡាវ៉ះ និងស៊ូជូទថ្លែងអំណរគុណ។

**ច្បាប់ទាក់ទងនិងម៉ាស្ជិទ៖** ការសាងសងម៉ាស្ជិទជាប្រការចាំបាច់ទៅតាមស្ថានភាពដែលត្រូវការ វាជាកន្លែងដែលអល់ឡោះស្រលាញ់ជាទីបំផុត។ ហារ៉មមិនឱ្យមានក្នុងវានោះ ដូចជា: តន្ត្រី ការទះដៃ ការច្រៀងកំណាព្យដែលហារ៉ម ការនៅចំរុះគ្នារវាងបុរសនិងស្ត្រី ការរួមដំណេក ការលក់ដូរ ហើយស៊ូណាតឱ្យតបចំពោះ

គេវិញថា: អល់ឡោះនឹងមិនផ្តលការចំណេញលើការលក់ដូររបស់អ្នកឡើយ ការប្រកាសស្វែងរករបស់ដែលបាត់ក្នុងម៉ាស្ជិទ ស៊ូណាត់សម្រាប់អ្នកដែលបានលឺតបវិញថា: អល់ឡោះនឹមិនត្រលប់វាមកអ្នកវិញឡើយ។ គេអនុញ្ញាតឱ្យបង្រៀនក្មេងៗដែលមិនបង្ករឱ្យមានគ្រោះថ្នាក់ដល់ពួកគេ កិច្ចសន្យាអាពាហ៍ពិពាហ៍ ការដោះស្រាយបញ្ហា ការសូត្រកំណាព្យដែលគេអនុញ្ញាត គេងនៅក្នុងវាសម្រាប់អ្នកអ៊ីកតិកាហ្វ និងក្រៅពីគេ។សម្រាកសម្រាប់ភ្ញៀវ អ្នកជំងឺ ឬគេងបន្តិចបន្តួច។ស៊ូណាត់ត្រូវការពារអំពីសម្លេងឡូឡា ការឈ្លួសប្រកែកគ្នា ការនិយាយច្រើន តម្លើងសម្លេងខ្លាំងដោយការមិនពេញចិត្ត និងការយកធ្វើជាផ្លូវដោយគ្មានការចាំបាច់។ មិនគប្បីនិយាយច្រើនអំពីប្រការលោកិយ៍នៅក្នុងវា ហើយមិនត្រូវប្រើប្រាសកំរាលព្រំ ឬអំពូល ឬអគ្គីសនីយ៍អំពីវាសម្រាប់ប្រើក្នុងពិធី មង្គលការ ឬ ពិធីរំលែកទុក្ខ។

<u>ការដាស់រំឭក៖</u>

❖ **មានការបង្គាប់ពីណាពីឱ្យរៀបសាហ្វ ដោយគាត់បានមានប្រសាសន៍របស់គាត់ថា** មានន័យថា «**ចូរពួកអ្នករៀបជួររបស់ពួកអ្នកឱ្យស្មើ បើមិនដូច្នោះទេអល់ឡោះនឹងឱ្យពួកអ្នកខ្វែងគំនិតគ្នា**»។(អាល់ពូខរី និងមូស្លីម)

មានន័យថា«**នួកម៉ានបាននិយាយថាខ្ញុំបានឃើញបុរសម្នាក់ឈរកៀកស្មារបស់គេជាមួយស្មាមិត្តភ័ក្តិរបស់គេ ជង្គង់របស់គេកៀកនឹងជង្គង់មិត្តភ័ក្តិរបស់គេ ហើយភ្នែកគោលរបស់គេកៀកនឹងភ្នែកគោលមិត្តភ័ក្តិរបស់គេ**»។(អាពូទើវ៉ូទ)

❖ សឡាតចាម៉ាអះជាកាតព្វកិច្ចចំពោះបុរស ទោះបីក្នុងការធ្វើដំណើរ បើសិនជាអាច។ គាត់បានទូន្មាននិងព្រមានចំពោះអ្នកដែលបោះបង់វា ឬអ្នកដែលព្រងើយកន្តើយចំពោះសឡាត។ ពីព្រោះវាជាសញ្ញាសំគាល់របស់អ្នកមានជំនឿ ហើយវាខុសពីសញ្ញាសម្គាល់របស់ពួកមូណាហ្វីគីន។ ណាពីបានមានប្រសាសន៍ថា៖មានន័យថា «**ខ្ញុំសូមស្បថចំពោះអល់ឡោះ! ខ្ញុំពិតជាមានបំណងចង់ឱ្យគេប្រមូលអុស បន្ទាប់មកឱ្យអាហ្សានហៅមកសឡាត បន្ទាប់មកខ្ញុំប្រើឱ្យបុរសម្នាក់ធ្វើអ៊ីមុាំ ហើយខ្ញុំនឹងទៅរកក្រុមប្រុសៗ (ដែលមិនមកសឡាត) ខ្ញុំនឹងដុតផ្ទះរបស់ពួកគេ**»។(អាល់ពូខរី និងមូស្លីម)

# ប្រភេទហ្សាកាត់:

**ហ្សាកាត់មានបួនប្រភេទ:**

១.សត្វពាហនៈដែលគេចិញ្ចឹម
២.ផលដែលចេញពីដី
៣.តម្លៃ
៤.ទំនិញជួញដូរ។

**លក្ខខណ្ឌដែលចាំបាច់:**

**មិនចាំបាច់ហ្សាកាត់ទេ លើកលែងតែមានលក្ខខណ្ឌប្រាំយ៉ាង :**

១.ឥស្លាម ២.មានសិទ្ធិសេរីភាព
៣.គ្រប់ចំនួននីសប ៤. ជាកម្មសិទ្ធិផ្ទាល់ខ្លួន
៥.គម្រប់ខួបលើកលែងតែផលដែលចេញពីដី។

**ហ្សាកាត់សត្វពាហនៈ** : ហ្សាកាត់សត្វពាហនៈមានបីប្រភេទ : សត្វអូដ្ឋ សត្វគោ សត្វពពែ។មានពីរលក្ខខណ្ឌដែលចាំបាច់ត្រូវចេញហ្សាកាត់ចំពោះសត្វពាហនៈ

១.ចិញ្ចឹមបានគ្រប់មួយខួប ឬលើស
២.សម្រាប់យកទឹកដោះនិងកូនមិនមែនសម្រាប់ប្រើទេ ។ តែបើសម្រាប់ជំនួញវិញ ត្រូវចេញហ្សាកាត់ជាតម្លៃទំនិញជួញដូរ។

**ហ្សាកាត់សត្វអូដ្ឋ :**

| ចំនួន | ១ - ៤ | ៥ - ៩ | ១០ - ១៤ | ១៥ - ១៩ | ២០ - ២៤ | ២៥ - ៣៥ | ៣៦ - ៤៥ | ៤៦ - ៦០ | ៦១- ៧៥ | ៧៦ - ៩០ | ៩១- ១២០ |
|---|---|---|---|---|---|---|---|---|---|---|---|
| ហ្សាកាត់ | មិនទាន់គ្រប់ហ្សាកាត់ | សត្វពពែ១ក្បាល | សត្វពពែ២ក្បាល | សត្វពពែ៣ក្បាល | សត្វពពែ៤ក្បាល | សត្វអូដ្ឋ១ក្បាល អាយុ១ឆ្នាំ | សត្វអូដ្ឋ១ក្បាល អាយុ២ឆ្នាំ | សត្វអូដ្ឋ១ក្បាល អាយុ៣ឆ្នាំ | សត្វអូដ្ឋ ១ក្បាលអាយុ៤ឆ្នាំ | សត្វអូដ្ឋ ២ក្បាលអាយុ២ឆ្នាំ | សត្វអូដ្ឋ ២ក្បាលអាយុ៣ឆ្នាំ |

បើសិនជាលើសពី១២០ គឺរាល់៥០ក្បាលត្រូវជូកសត្វអូដ្ឋ១ក្បាលអាយុ៣ឆ្នាំ ហើយរាល់៤០ក្បាលជូកសត្វអូដ្ឋ១ក្បាលអាយុ២ឆ្នាំ។
«بنت المخاض» មានន័យថា សត្វអូដ្ឋអាយុ១ឆ្នាំ,«بنت اللبون» សត្វអូដ្ឋអាយុ២ឆ្នាំ, «الحقة» សត្វអូដ្ឋអាយុ៣ឆ្នាំ, «الجذعة» សត្វអូដ្ឋអាយុ៤ឆ្នាំ។

## ហ្សាកាត់គោ :

| ចំនួន | ១ - ២៩ | ៣០ - ៣៩ | ៤០ - ៥៩ |
|---|---|---|---|
| ហ្សាកាត់ | មិនហ្សាកាត់ | គោឈ្មោលឬញីអាយុ១ឆ្នាំចំនួន១ក្បាល | គោឈ្មោលឬញីអាយុ២ឆ្នាំចំនួន១ក្បាល |

បើសិនគោដល់៦០ក្បាលឡើងទៅ រាល់៣០ក្បាលត្រូវដកហ្សាកាត់គោឈ្មោលអាយុ១ឆ្នាំចំនួន១ក្បាល ហើយរាល់គោ៤០ក្បាលត្រូវដកហ្សាកាត់គោញីអាយុ២ឆ្នាំចំនួន១ក្បាល។ («تبيع أو تبيعة» គោអាយុ១ឆ្នាំ។ «مسن أو مسنة» គោអាយុ២ឆ្នាំ)។

## ហ្សាកាត់ពពែ :

| ចំនួន | ១ - ៣៩ | ៤០ - ១២០ | ១២១ - ២០០ | ២០១ - ៣៩៩ |
|---|---|---|---|---|
| ហ្សាកាត់ | មិនហ្សាកាត់ | ពពែ១ក្បាល | ពពែ២ក្បាល | ពពែ៣ក្បាល |

បើចំនួនពពែចាប់ពី៤០០ឡើងទៅ រាល់ពពែ១០០ក្បាលត្រូវហ្សាកាត់ពពែចំនួន១ក្បាល។ ពពែដែលគេមិនយកមកហ្សាកាត់មានដូចជា ពពែបា ពពែចាស់ ពពែខ្វាក់ ពពែមានកូនតូច ពពែមេ និងពពែថ្លៃ។ «جذعة الضأن» ពពែអាយុ៦ខែ។ «ثني المعز» ពពែអាយុ១ឆ្នាំ។

**ហ្សាកាត់ផលដែលចេញពីក្នុងដី៖** ចាំបាច់ត្រូវហ្សាកាត់ផលដំណាំដែលចេញពីក្នុងដីទាំងគ្រាប់និងផ្លែ ដោយមានលក្ខខណ្ឌបីយ៉ាងគឺ

១.គ្រាប់ធញ្ញជាតិ គេអាចវាល់និងរក្សាទុកបាន។ឧទាហរណ៍ដូចជាស្រូវបាឡេ ស្រូវសាលី ស្រូវគឺជាគ្រាប់ធញ្ញជាតិ ហើយផ្លែឈើមានដូចជាទំពាំងបាយជូ និងផ្លែល្មើ។ ឯចំណែកអ្វីដែលគេមិនអាចវាល់ និងថ្លឹងហើយរក្សាទុកមិនបាន ដូចជាបន្លែ និងបន្លែអន្លក់។ល។គេមិនយកមកហ្សាកាត់នោះទេ។

២. គ្រប់ចំនួនកំណត់ : គឺចាប់៦៥៣គីឡូក្រាមឡើងទៅ។

៣. ផលដំណាំនោះជាកម្មសិទ្ធិរបស់គេខណៈពេលដែលត្រូវហ្សាកាត់។ ពេលដែលចាំបាច់ត្រូវហ្សាកាត់គឺនៅពេលប្រមូលផល។ ការប្រមូលគឺនៅពេលវាទុំក្រហម ឬពណ៌លឿង។ ចំណែកឯដំណាំ(គ្រាប់ធញ្ញជាតិ)នៅពេលដែលគ្រាប់វារឹងល្អ និងស្ងួត។

ត្រូវហ្សាកាត់ (១០%) ចំពោះដាំណាំដែលប្រើប្រាស់ទឹកដោយគ្មានការប្រើកម្លាំងដូចជាស្រោចស្រពដោយទឹកភ្លៀង និងទឹកទន្លេ។ ត្រូវហ្សាកាត់ (៥%) ចំពោះដាំណាំដែលស្រោចទឹកដោយចំណាយលុយ និងប្រើកម្លាំងដូចជាបូមទឹកអណ្ដូង និងដោយមធ្យោបាយផ្សេងទៀត។ រីឯដំណាំដែលស្រោចទឹកដោយលំបាកនៅថ្ងៃ



ខ្លះ ហើយថ្ងៃខ្លះទៀតងាយស្រួលនោះគឺត្រូវគិតទៅតាមភាគច្រើនភាគតិច ហើយត្រូវគិតទៅតាមចំនួនថ្ងៃដែលពិបាកនិងចំនួនថ្ងៃដែលមិនពិបាក។

**ហ្សាកាត់តម្លៃមានពីរប្រភេទ៖**

**១.មាស** មិនត្រូវហ្សាកាត់ទេ លុះត្រាតែមានទម្ងន់ស្មើនឹង (៨៥) ក្រាម។

**២.ប្រាក់** មិនត្រូវហ្សាកាត់ទេ លុះត្រាតែមានទម្ងន់ស្មើនឹង (៥៩៥) ក្រាម។ សាច់ប្រាក់ និងរូបិយប័ណ្ណមិនត្រូវហ្សាកាត់ទេ ទាល់តែមានតម្លៃនៃក្រដាស់ស្មើនឹងមាស និងប្រាក់នៅពេលដល់វេលាហ្សាកាត់។ ហ្សាកាត់តម្លៃគឺ (២.៥%)។

**គ្រឿងអលង្ការដែលគេអនុញ្ញាត៖** គ្រឿងអលង្ការដែលទុកសម្រាប់ប្រើប្រាស់គឺមិនត្រូវហ្សាកាត់នោះទេ។ រីឯរបស់ដែលទុកសម្រាប់ជួល ឬសន្សំទុកគឺត្រូវហ្សាកាត់។ តាមទម្លាប់គេអនុញ្ញាតឱ្យស្ត្រីពាក់មាស និងប្រាក់ ហើយក៏គេអនុញ្ញាតឱ្យស្រោបប្រាក់បន្តិចបន្តួចទៅលើគ្រឿងចានឆ្នាំងរបស់ប្រើប្រាស់។ មិនត្រឹមតែប៉ុណ្ណោះគេអនុញ្ញាតឱ្យបុរសពាក់
ចិញ្ចៀននិងវែនតាដែលធ្វើពីប្រាក់។ល។ រីឯមាសវិញហាម៉ាមយកទៅស្រោបលើរបស់ប្រើប្រាស់ តែគេអនុញ្ញាតឱ្យបុរសអាចប្រើប្រាស់វាបានបន្តិចបន្តួចដូចជា ធ្វើជាធ្មេញអារ និងស្រោបធ្មេញ ដោយមិនប្រដូចខ្លួននឹងស្ត្រី។

**អ្នកដែលទ្រព្យរបស់គាត់ម្តងកើនម្តងចុះ** ហើយពិបាកក្នុងការហ្សាកាត់ឱ្យគ្រប់ចំនួនខួបរបស់វា។ គេហ្សាកាត់តាមថ្ងៃដែលគេកំណត់ក្នុងមួយឆ្នាំ ដល់ថ្ងៃនោះគេពិនិត្យមើលជាក់ស្តែង តើគេមានលុយប៉ុន្មាន? គេត្រូវហ្សាកាត់ (២.៥%) ទោះបីជាទ្រព្យសម្បត្តិរបស់គេមិនគ្រប់ខួបក៏ដោយ។ អ្នកដែលមានប្រាក់ខែ ឬក៏មានអ្វីសម្រាប់ជួលដូចជាផ្ទះ ដី បើសិនជាគេមិនបានសន្សំទុកប្រាក់ខែរបស់គេ ឬថ្លៃឈ្នួលនោះគឺគេមិនត្រូវហ្សាកាត់ទេ ទោះបីជាច្រើនក៏ដោយ។ តែបើសិនជាគេសន្សំសល់ ហើយគ្រប់ខួប គេត្រូវហ្សាកាត់ តែបើសិនជាគេពិបាក គេអាចកំណត់ថ្ងៃណាមួយដើម្បីហ្សាកាត់ ដូចដែលបានលើកឡើងខាងលើ។

**ហ្សាកាត់បំណុល** ដែលអ្នកមានជំពាក់ ឬគេអាចទារយកមកវិញបាននោះ គេត្រូវហ្សាកាត់សម្រាប់អ្វីដែលកន្លងជាច្រើនឆ្នាំ និងច្រើនយ៉ាងណាក៏ដោយ នៅពេលដែលគេទារបានមកវិញ។ តែបើសិនជាគេគ្មានលទ្ធភាព ដូចជាអ្នកក្ស័យធនជំពាក់បំណុលនោះ គេមិនត្រូវហ្សាកាត់ទេ ពីព្រោះគេគ្មានសិទ្ធិចាត់ចែងទ្រព្យទាំងនោះឡើយ។

**ហ្សាកាត់ទំនិញជួញដូរ**

មិនត្រូវហ្សាកាត់ទំនិញជួញដូរទេ លើកលែងតែមានលក្ខខណ្ឌបួនយ៉ាងគឺ

១.ជាម្ចាស់កម្មសិទ្ធិ
២.មានបំណងចង់យកទ្រព្យនោះទៅធ្វើជំនួញ
៣. តម្លៃរបស់វាគ្រប់ចំនួន តាមនីសបមាស និងប្រាក់
៤. គ្រប់ខួប។ បើសិនជាមានគ្រប់លក្ខខណ្ឌទាំងអស់នេះត្រូវហ្សាកាត់ជាតម្លៃ។ តែបើគេមានមាស ប្រាក់ និងលុយ គេត្រូវសរុបចូលគ្នាជាមួយទំនិញជួញដូរដើម្បីបង្គ្រប់ចំនួន។ បើសិនជាគេមានបំណងចង់យកលុយធ្វើជំនួញនេះទៅទិញរបស់ប្រើប្រាស់ដូចជាទិញសម្លៀកបំពាក់ ទិញផ្ទះ ទិញឡាន និងទ្រព្យផ្សេងទៀត គឺគេមិនត្រូវហ្សាកាត់ទេ។ តែបើសិនជាគេមានបំណងចង់យកទ្រព្យសម្បត្តិនោះធ្វើការជួញដូរវិញគឺត្រូវបន្តរាប់ឱ្យគ្រប់មួយខួប[1]។

**ហ្សាកាត់ហ្វិត្រោះ** ជាកាតព្វកិច្ចលើបុគ្គលឥស្លាមគ្រប់រូបដែលមានទ្រព្យសម្បត្តិលើសពីតម្រូវការរបស់គេ និងក្រុមគ្រួសាររបស់គេនៅយប់ និងនៅថ្ងៃបុណ្យរ៉យ៉ា។ ចំនួនហ្សាកាត់របស់វាគឺ **(២.២៥គីឡូក្រាម)** នៃចំណីអាហារនៅក្នុងស្រុកសម្រាប់បុគ្គលម្នាក់ទាំងប្រុសទាំងស្រី។ អ្នកដែលទទួលបន្ទុក ហ្សាកាត់គឺត្រូវចេញហ្សាកាត់ឱ្យអ្នកដែលត្រូវ ហ្សាកាត់នៅយប់ថ្ងៃរ៉យ៉ា បើសិនជាគេមានលទ្ធភាព។ សូណាត់ឱ្យហ្សាកាត់នៅថ្ងៃរ៉យ៉ាមុននឹងសឡាត ហើយគេមិនអនុញ្ញាតឱ្យពន្យាររហូតដល់សឡាតថ្ងៃរ៉យ៉ារួច។ គេអនុញ្ញាតឱ្យហ្សាកាត់មុនថ្ងៃរ៉យ៉ាចំនួនមួយថ្ងៃឬពីរថ្ងៃ។
គេអនុញ្ញាតផ្តល់ហ្សាកាត់របស់មនុស្សច្រើននាក់ឱ្យទៅមនុស្សម្នាក់ ហើយហ្សាកាត់របស់មនុស្សម្នាក់ផ្តល់ជូនមនុស្សច្រើននាក់។

**ការចេញហ្សាកាត់** ចាំបាច់ត្រូវតែចេញហ្សាកាត់ភ្លាមៗ។ អាណាព្យាបាលត្រូវចេញហ្សាកាត់ឱ្យក្មេងតូច និងមនុស្សឆ្កួត។ ស៊ូណាត់ឱ្យចេញហ្សាកាត់ដោយបើកចំហរ និងដើរចែកជូនវាដោយខ្លួនឯង។ លក្ខខណ្ឌចេញហ្សាកាត់នេះគឺតម្រូវឱ្យនៀតចំពោះអ្នកមានកាតព្វកិច្ច (មូកាល់ឡាហ្វ)។ មិនក្លាយជាហ្សាកាត់ទេ បើសិនជាគេនៀតសហ្ទាកោះសុទ្ធសាធ ទោះបីជាគេធ្វើសហ្ទាកោះទាំងអស់ទ្រព្យសម្បត្តិរបស់គេ។ ជាការប្រសើរបំផុតគឺទ្រព្យហ្សាកាត់ទាំងអស់របស់គេ ផ្តល់ឱ្យពួកអ្នកក្រីក្រ

1 តម្លៃទំនិញជួញដូរដែលត្រូវហ្សាកាត់មានចំនួនស្មើនឹង៨៥ក្រាមនៃចំនួននីសបមាស ឬស្មើនឹង៥៩៥ក្រាមនៃចំនួនប្រាក់ចំនួនទំនិញជួញដូរនេះពេលចេញ គឺចេញតាមនីសបមាស និងប្រាក់។



នៅក្នុងប្រទេសរបស់គេ ហើយគេអនុញ្ញាតឱ្យបញ្ជូនវាទៅកាន់ប្រទេសដទៃទៀតបានដើម្បីជាប្រយោជន៍ស្របច្បាប់ណាមួយ។ គេអនុញ្ញាតឱ្យហ្សាកាត់សម្រាប់ពីរឆ្នាំមុន បើសិនជាវាគ្រប់ចំនួនត្រូវហ្សាកាត់ ហើយហ្សាកាត់នេះត្រឹមត្រូវ។

**អ្នកទទួលហ្សាកាត់៖** មានប្រាំបីក្រុម

១. អ្នកក្រតោកយ៉ាក ២. អ្នកក្រីក្រ ៣.អ្នកប្រមូលហ្សាកាត់

៤.អ្នកចូលសាសនាឥស្លាមថ្មីៗ ៥. ឈ្លើយសឹក ៦.អ្នកជំពាក់បំណុលគេ

៧.អ្នកតស៊ូក្នុងផ្លូវអល់ឡោះ ៨. អ្នកដំណើរដាច់

សង្វែង។ គេចែកឱ្យអ្នកទាំងនេះតាមកម្រិតនៃតម្រូវការរបស់ពួកគេ លើកលែងតែអ្នកប្រមូលហ្សាកាត់គេត្រូវឱ្យទៅតាមកម្រិតនៃថ្លៃឈ្នួលរបស់គាត់ ទោះបីគាត់ជាអ្នកមានក៏ដោយ។ ចេញហ្សាកាត់ឱ្យពួកអ្នកបះបោរ ពួកអ្នកឈ្លានពាន ក៏គេអនុញ្ញាតដែរ បើសិនជាពួកគេគ្រប់គ្រងលើប្រទេសរបស់គេ។ ម្យ៉ាងទៀតគេអនុញ្ញាត ឱ្យមេដឹកនាំមករឹបអូសយកហ្សាកាត់ដោយបង្ខំ ឬជម្រើស ទោះគាត់ដឹកនាំដោយយុត្តិធម៌ ឬអយុត្តិធម៌។

**គេមិនអនុញ្ញាតចេញហ្សាកាត់ឱ្យអ្នកកាហ្វៀរ** ទាសករ អ្នកមាន អ្នកនៅក្រោមបន្ទុកគ្រួសាររបស់ខ្លួន និងក្រុមគ្រួសារ ហ្ពានី ហាស្ជិម។ បើសិនជាគេផ្តល់ហ្សាកាត់ឱ្យអ្នកដែលគ្មានសិទ្ធិទទួលដោយខ្លួនគេមិនដឹង ហើយបន្ទាប់មកគេដឹងវិញ គឺហ្សាកាត់នោះមិនត្រឹមត្រូវនោះទេ។ លើកលែងតែគេផ្តល់ឱ្យអ្នកដែលគេគិតថាអ្នកនោះជាអ្នកក្រីក្រ តែក្រោយមកគេដឹងប្រាកដថា អ្នកនោះជាអ្នកមាន ដូច្នេះហ្សាកាត់នោះយកជាការបាន។

**សហ្ទាកោះដោយស្ម័គ្រចិត្ត** រ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា មានន័យថា « **ពិតណាស់ អ្វីដែលជាប់ទៅជាមួយនឹងអ្នកមានជំនឿនៃអំពើ និងផលបុណ្យរបស់គេបន្ទាប់ពីស្លាប់រួច គឺចំណេះដឹងដែលគេបានបង្រៀន និងផ្សព្វផ្សាយ។ កូនកតញ្ញូដែលគេបានបន្សល់។ គម្ពីរអាល់គួរអានដែលគេបន្សល់ជាមត៌ក ឬម៉ាស្ជិតដែលគេបានកសាង។ ឬផ្ទះដែលគេបានកសាងសម្រាប់អ្នកដំណើរ។ ឬព្រែកដែលគេបានជីកឱ្យមានទឹកហូរ។ ឬទ្រព្យសហ្ទាកោះដែលគេបានបញ្ចេញនៃទ្រព្យសម្បត្តិរបស់គេខណៈដែលគេមានសុខភាពល្អ និងនៅរស់រានមានជីវិត គឺអាចជាប់ទៅជាមួយខ្លួនគេក្រោយពេលស្លាប់**»។ (អ៊ីបនូម៉ាយ៉ះ)

# បួស

ប្អូសខែរ៉ម៉ាឧនជាកាតព្វកិច្ចលើរាល់បុគ្គលដែលជា អ្នកមូស្លីម មានប្រាជ្ញាដឹងក្តី (គ្រប់អាយុ) មានសមត្ថភាពបួស ចំពោះស្ត្រីវិញគឺគ្មានរដូវ និងគ្មានឈាមឆ្លងទន្លេ។ គេប្រើឱ្យក្មេងបួស បើសិនជាគេអាច ដើម្បីទម្លាប់ឱ្យគេរៀនបួស។ គេដឹងថាដល់ខែរ៉ម៉ាឧនដោយមានលក្ខណៈសំគាល់ពីរប្រការ :១.ឃើញកូនខែដោយមានសាក្សីជាអ្នកមូស្លីម ត្រឹមត្រូវ ដែលទទួលកាតព្វកិច្ច សូម្បីអ្នកនោះជាស្ត្រី ២.បង្គ្រប់ខែហ្សាក់ហ្ពាន៣០ថ្ងៃ។ កាតព្វកិច្ចបួសតមអាហារចាប់ផ្តើមពីអារុណរះពិតប្រាកដ(ហ្វាជើរស៊ទិក)រហូតដល់ថ្ងៃលិច។ បួសហ្សារហ្វូចាំបាច់ត្រូវនៀតមុនហ្វាជើរ។

<u>ប្រការដែលធ្វើឱ្យខូចបួសមាន :</u>

**១.រួមដំណេកតាមប្រដាប់ភេទ:** គេត្រូវបួសសង និងបង់ពិន័យដោយដោះលែងខ្ញុំបម្រើ បើអត់មានត្រូវបួសពីរខែជាប់គ្នា។ បើសិនជាគ្មានសមត្ថភាពត្រូវផ្តល់ចំណីអាហារឱ្យអ្នកក្រីក្រចំនួន៦០នាក់ តែបើសិនជាអត់ទៀត គ្មានបញ្ហាអ្វីចំពោះគេនោះទេ។

**២.ចេញទឹកកាម:** ដោយឱបថើប ឬស្ទាបអង្អែល ឬធ្វើឱ្យចេញទឹកកាម។ ចំណែកឯអ្នកដែលដេកយល់សប្តិអត់មានបញ្ហាអ្វីទេ។

**៣.ហូប និងផឹកទឹកដោយចិត្តចង់** បើសិនជាគេភ្លេច បួសរបស់គេត្រឹមត្រូវ។

**៤.ចេញឈាម**ដោយការជប់ឈាម ឬការបរិច្ចាគឈាម។ ចំណែកឯការយកឈាមបន្តិចបន្តួចដើម្បីពិនិត្យជំងឺ ឬក៏ចេញឈាមដោយអចេតនាដូចជា មុខរបួស ហូរឈាមតាមច្រមុះ គឺមិនធ្វើឱ្យខូចបួសទេ។

**៥.ក្អួតដោយចិត្តចង់។** បើសិនជាមានធូលីចូលក្នុងបំពង់ក ឬខ្ចូរមាត់ ឬបញ្ចូលទឹកក្នុងច្រមុះ ហើយទឹកចូលក្នុងបំពង់ក ឬស្រមើលស្រមៃរួចក៏ចេញទឹកកាម ឬក៏យល់សប្តិ ឬក៏ចេញឈាម ឬក្អួតដោយអចេតនា នោះបួសរបស់គេមិនខូចទេ។ ហើយក៏មិនត្រូវបួសសងដែរ លើកលែងតែការរួមដំណេក។

អ្នកដែលហូបអាហារដោយគិតស្មានថានៅយប់នៅឡើយ តែក្រោយមកស្រាប់តែដឹងច្បាស់ថាជាពេលថ្ងៃគឺគេត្រូវបួសសងវិញ។ អ្នកដែលបរិភោគអាហារនៅពេលយប់ដោយសង្ស័យថាអារុណរះគឺបួសរបស់គេមិនខូចទេ។ តែបើសិនជាគេបរិភោគនៅពេលថ្ងៃដោយសង្ស័យថាថ្ងៃលិចគឺគេត្រូវបួសសងវិញ។

**ច្បាប់អ្នកដែលស្រាយបួស:** គេហាមស្រាយបួសនៅខែរ៉ម៉ាឧនចំពោះអ្នកដែលគ្មានច្បាប់លើកលែងឱ្យគេស្រាយបួស។តែចាំបាច់ត្រូវស្រាយបួសចំពោះស្ត្រីមករដូវ និងឈាមឆ្លងទន្លេ និងអ្នកដែលចង់សង្គ្រោះខ្លួនពីគ្រោះថ្នាក់ ឬក្តីវិនាស។ ស៊ូណាត់ចំពោះអ្នកដែលធ្វើដំណើរដែលគេអនុញ្ញាតឱ្យសឡាតកសើរគឺអាចស្រាយ



បួសបាន បើសិនជាបួសធ្វើឱ្យគេមានការលំបាក។ គេអនុញ្ញាតចំពោះអ្នកជំងឺដែលខ្លាចមានគ្រោះថ្នាក់។ គេអនុញ្ញាឱ្យអ្នកនៅក្នុងភូមិដែលមានបំណងចង់ចេញដំណើរនៅពេលថ្ងៃអាចស្រាយបួសបាន ហើយស្ត្រីដែលមានផ្ទៃពោះនិងស្ត្រីដែលបំបៅកូនខ្លាចមានគ្រោះថ្នាក់ដល់ម្ដាយ និងកូន ឬខ្លាចមានគ្រោះថ្នាក់កូន តែពួកអ្នកទាំងនោះត្រូវបួសសងវិញ។ ក៏ប៉ុន្តែចំពោះស្ត្រីដែលមានផ្ទៃពោះ និងស្ត្រីដែលបំបៅកូនត្រូវបួសសង ហើយផ្ដល់ចំណីអាហារឱ្យអ្នកក្រីក្រជារៀងរាល់ថ្ងៃបន្ថែមទៀត បើអ្នកទាំងពីរខ្លាចមានគ្រោះថ្នាក់ដល់កូនតែប៉ុណ្ណោះ។
ចំពោះអ្នកដែលអសមត្ថភាពបួសដោយសារភាពចាស់ជរា ឬមានជំងឺដែលអត់សង្ឃឹមនឹងជាគេអនុញ្ញាតស្រាយបួសតែត្រូវផ្ដល់ចំណីអាហារឱ្យអ្នកក្រីក្រម្នាក់ជារៀងរាល់ថ្ងៃ ហើយមិនចាំបាច់បួសសងវិញទេ។
អ្នកដែលពន្យារការបួសសងដោយសារអសមត្ថភាពរហូតដល់ខែរ៉ម៉ាឌនឆ្នាំថ្មីទៀតគឺចាំបាច់ត្រូវឱ្យបួសសងវិញតែប៉ុណ្ណោះ។ តែបើគេពន្យារពេលដោយគ្មានច្បាប់លើកលែងនោះគេត្រូវបួសសង និងផ្ដល់ចំណីអាហារឱ្យអ្នកក្រីក្រម្នាក់ជារៀងរាល់ថ្ងៃ។ បើសិនជាបោះបង់ការបួសសងដោយសារអសមត្ថភាពរហូតដល់ស្លាប់នោះគឺគ្មានបញ្ហាអ្វីនោះទេ។ តែបើសិនជាគេមិនបានបួសសងដោយគ្មានច្បាប់លើកលែង គឺត្រូវផ្ដល់ចំណីអាហារឱ្យអ្នកក្រីក្រម្នាក់ជារៀងរាល់ថ្ងៃ។ហើយស៊ុណណាត់ចំពោះបងប្អូនរបស់គេឱ្យបួសសងជំនួសក្នុងខែរ៉ម៉ាឌននូវចំនួនថ្ងៃដែលគេធ្វេសប្រហែស ដូច្នេះដែរការបួសលាបំណន់ ត្រូវធ្វើជំនួសគេនូវរាល់ការលាបំណន់ជាការប្រតិបត្តិចំពោះអល់ឡោះ។ អ្នកដែលស្រាយបួសដោយសារករណីលើកលែង ក្រោយមកករណីលើកលែងនោះបានបាត់ទៅវិញនៅពេលថ្ងៃនៃខែរ៉ម៉ាឌន ក៏ដូចគ្នាផងដែរ កាហ្វៀរចូលឥស្លាម ឬស្ត្រីដែលជ្រះស្អាតពីឈាមរដូវ ឬជាពីជំងឺ ឬត្រលប់មកពីធ្វើដំណើរវិញ ឬក្មេងដែលគ្រប់អាយុ ឬមនុស្សឆ្កួតដែលជាវិញនៅពេលថ្ងៃនៃខែរ៉ម៉ាឌនខណៈដែលពួកគេមិនបួសនោះចាំបាច់ត្រូវឱ្យពួកគេបួសសងវិញ សូម្បីតែពួកគេបួសក្នុងរយៈពេលដែលសេសសល់ក៏ដោយ។ ចំពោះអ្នកដែលច្បាប់លើកលែងឱ្យស្រាយបួសក្នុងខែរ៉ម៉ាឌន គេមិនអនុញ្ញាតឱ្យអ្នកនោះបួសអ្វីផ្សេងនោះទេ។

## បួសស៊ូណាត់

ប្រសើរបំផុតគឺបួសមួយថ្ងៃស្រាយមួយថ្ងៃ។ បន្ទាប់មក គឺបួសនៅថ្ងៃចន្ទនិងថ្ងៃព្រហស្បតិ៍ បន្ទាប់មកទៀតគឺបួសក្នុងមួយខែបីថ្ងៃល្អបំផុតនៅថ្ងៃទី **(១៣.១៤.១៥)** រាប់តាមខែចន្ទគតិ និងស៊ុណណាត់ឱ្យបង្កើនការបួសនៅខែមូហ៊ើរ៉ម និងខែស្សាក់ហ្ពាន ថ្ងៃអាស្ហ៊ូរ៉ា ថ្ងៃអារ៉ហ្វះ និងប្រាំមួយថ្ងៃនៃខែស្សាវ៉ាល់ ហើយមឹករូសបួសនៅខែរ៉ហ្ជាប់តែមួយ ថ្ងៃជុំអាត់ និងថ្ងៃសៅរ៍ បួសថ្ងៃសង្ស័យគឺថ្ងៃទី៣០ស្សាក់ហ្ពាន





កាលណាថ្ងៃនោះមេឃស្រឡះ។ គេហាមបួសថ្ងៃរ៉យ៉ាទាំងពីរ ថ្ងៃតើស្សរីក លើកលែងអ្នកដែលត្រូវសំឡេះសត្វសម្រាប់ហាជ្ជតាម៉ាត្តុក និងកីរ៉ន។

**កំណត់សម្គាល់**

❖ អ្នកដែលមានហាទីសធំដូចជាជូនុប និងស្ត្រីមករដូវ និងឈាមឆ្លងទន្លេ បើអ្នកទាំងពីរជ្រះស្អាតមុនពេលទៀបភ្លឺ គឺគេអនុញ្ញាតឱ្យពួកគេពន្យារការមុជទឹករហូតដល់ក្រោយអាហារូរួច តែត្រូវរួសរាន់ហូបបាយបួសមុនអាហារូន ហើយបួសរបស់ពួកគេត្រឹមត្រូវ។

❖ គេអនុញ្ញាតឱ្យស្ត្រីលេបថ្នាំពន្យាការមករដូវនៅក្នុងខែរ៉ម៉ាឌនក្នុងគោលបំណងចូលរួមធ្វើអំពើកុសលជាមួយពួកអ្នកមូស្លីម បើសិនជាគ្មានការប៉ះពាល់។

❖ គេអនុញ្ញាតឱ្យអ្នកបួសលេបទឹកមាត់ឬស្លេស បើមាននៅក្នុងបំពង់ក។

❖ ណាពី( )បានមានប្រសាសន៍ថា "لاتزالُ أُمَّتي بِخيرٍ ما عَجَّلُوا الإفْطَارَ وأَخَّرُوا السُّحُورَ" មានន័យថា «**ប្រជាជាតិរបស់ខ្ញុំនៅតែប្រសើរជានិច្ច ដរាបណាពួកគេរួសរាន់ស្រាយបួស និងពន្យារការហូបបាយបួស**»។ (អះម៉ាត់)

"لَا يَزَالُ الدِّينُ ظَاهِرًا مَا عَجَّلَ النَّاسُ الفِطْرَ لِأَنَّ الْيَهُودَ وَالنَّصَارَى يُؤَخِّرُوْنَ"ណាពីបន្តទៀតថា «**សាសនាឥស្លាមនៅតែខ្ពស់ត្រដែតជានិច្ច ដរាបណាមនុស្សរួសរាន់ស្រាយបួស។ ពីព្រោះពួកជីហ្វ និងពួកគ្រិស្ត ពួកគេពន្យារការស្រាយបួស**»។ (អាពូទើវ៊ូទ)

➢ ស៊ូណាត់ឱ្យទូអានៅពេលស្រាយបួស ណាពី បានមានប្រសាសន៍ថា "إِنَّ لِلصَّائِمِ عِنْدَ فِطْرِهِ دَعْوَةً لَاتُرَدُّ" មានន័យថា«**ជាការពិតណាស់ សម្រាប់អ្នកបួស ខណៈពេលស្រាយបួស គឺទូអាគេមិនច្រានចោលនោះឡើយ**»។ (អ៊ីបនូម៉ាយ៉ះ)

ទូអានៅពេលស្រាយបួស ដែលមានក្នុងរីវ៉ាយ៉ាត់ ដោយ ណាពី បានទូអាថា: "ذَهَبَ الظَّمَأُ وَابْتَلَّتِ الْعُرُوقُ وَثَبَتَ الْأَجْرُ إِنْ شَاءَ اللَّهُ" មានន័យថា «**បាត់ស្រេកទឹក។ សរសៃឈាមមានសំណើម និងទទួលបានផលបុណ្យ អិន ស្សាអល់ឡោះ**»។(អាពូទើវ៊ូទ)

➢ ស៊ូណាត់ឱ្យស្រាយបួសនឹងផ្លែល្មើស្រស់ តែបើគ្មាន ជាមួយនឹងល្មើទុំ បើអត់មានទៀត ដោយផឹកទឹក។

➢ អ្នកបួសគប្បីជៀសវាងការប្រើប្រាស់ថ្នាំលាបត្របកភ្នែក ថ្នាំបន្តក់ភ្នែក ឬថ្នាំដាក់ត្រចៀកក្នុងពេលកំពុងបួស ដោយកុំគិតពីការខ្វែងយោបល់គ្នា។ តែបើចាំបាច់ប្រើដូចជាព្យាបាលជំងឺគឺអត់មានបញ្ហាអ្វីទេ ទោះបីជារសជាតិនៃថ្នាំព្យាបាលនោះជ្រាបដល់បំពង់កក៏ដោយ គឺបួសរបស់គេត្រឹមត្រូវ។

➢ ស៊ូណាត់ឱ្យប្រើប្រាស់ឈើដុះធ្មេញនៅគ្រប់ពេលនៃការបួសមិនមែនមឹករ៉ូសទេ។

➢ អ្នកបួសចាំបាច់ត្រូវបោះបង់ការនិយាយដើមគេ ញុះញង់គេ និងនិយាយកុហក។ល។ បើសិនជាមាននរណាម្នាក់ជេរគេ គេត្រូវនិយាយថា (ខ្ញុំបួស)។ គេត្រូវ



ថែរក្សាអណ្តាតរបស់គេ និងអវៈយវៈរបស់គេពីអំពើបាប គឺគេរក្សាបួសរបស់គេ។ ណាពីបានមានប្រសាសន៍ថា មានន័យថា«**អ្នកណាមិនបានបោះបង់ចោលពាក្យសម្តីកុហក និងអំពើបោកប្រាស់ទេនោះគឺអល់ឡោះមិនត្រូវការការបោះបង់អាហារ និងស្រេកទឹករបស់គេនោះទេ**»។ (អះម៉ាត់)

➤ ស៊ូណាត់សម្រាប់អ្នកបួស បើគេអញ្ជើញទៅបរិភោគអាហារ ហើយគេកំពុងបួស គឺគេត្រូវទូអាឱ្យម្ចាស់អញ្ជើញនោះតែប្រសិនបើគេអត់បួសគឺគេត្រូវអញ្ជើញទៅហូប

➤ យប់ឡៃឡាតុលកទើរគឺជាយប់ដ៏ប្រសើរបំផុតក្នុងមួយឆ្នាំ។ ជាពិសេសគឺផលបុណ្យនៅ១០យប់ចុងក្រោយនៃខែរ៉ម៉ាឌន។ ប្រាកដណាស់មានយប់មួយជាយប់ឡៃឡាតុលកទើរ (ليلة القدر) ជាពិសេសគឺយប់ទី២៧។ អំពើល្អនៅយប់នោះប្រសើរជាងការធ្វើអំពើល្អ ចំនួនមួយពាន់ខែ។ យប់នេះមានសញ្ញាសម្គាល់ដូចជាថ្ងៃរះនៅពេលព្រឹកភ្លឺថ្លា មិនសូវក្តៅខ្លាំង អាកាសធាតុបិតក្នុងកម្រិតមធ្យម ជួនកាលមនុស្សជួបនឹងយប់នេះ តែគេមិនដឹងខ្លួន។ ដូច្នេះ ចាំបាច់ត្រូវខិតខំធ្វើអ៊ីបាហ្ទាត់ក្នុងខែរ៉ម៉ាឌន ជាពិសេសនៅ១០យប់ចុងក្រោយ។

ប្រុងប្រយ័ត្នកុំឱ្យខកខានក្នុងយប់ណាដោយពុំបានក្រោកសឡាត។ បើសិនជាគេសឡាតតារ៉ាវេសរួមគ្នា គេពុំត្រូវចេញមុននឹងអ៊ីមាំបញ្ចប់សឡាតតារ៉ាវេសនោះទេ ដើម្បីទទួលបាននូវការកត់ត្រាឱ្យគេបានផលបុណ្យស្មើនឹងសឡាតពេញមួយយប់។

➤ ចំពោះអ្នកដែលចាប់ផ្តើមបួសស៊ូណាត់ យកល្អគួរតែបួសឱ្យចប់នៅថ្ងៃនោះ តែមិនវ៉ាជិបនោះទេ។ តែបើសិនជាគេចង់ឈប់បួសវិញគឺគ្មានបាបអ្វីនោះទេ ហើយក៏មិនត្រូវបួសសងវិញដែរ។

➤ <u>**អៀកទីកាហ្វ**</u> គឺជាការស្នាក់នៅក្នុងម៉ាស្ជិតរបស់អ្នកឥស្លាមដែលមានប្រាជ្ញាដើម្បីគោរពប្រតិបត្តិចំពោះអល់ឡោះ។ លក្ខខណ្ឌ អ្នកដែលអៀកទីកាហ្វត្រូវជ្រះស្អាតពីហាទីសធំ។ អ្នកដែលអៀកទីកាហ្វមិនត្រូវចេញពីក្នុងម៉ាស្ជិតលើកលែងតែមានការចាំបាច់ ដូចជាការបរិភោគ បត់ជើងតូច ឬបត់ជើងធំ មុជទឹកវ៉ាជិបជាដើម។ ការអៀកទីកាហ្វត្រូវបានចាត់ទុកជាមោឃៈ បើចេញពីម៉ាស្ជិតដោយអត់មានការចាំបាច់ ហើយនឹងការរួមដំណេក។ ស៊ូណាត់អាចធ្វើបានគ្រប់ពេល ហើនៅក្នុងខែរ៉ម៉ាឌនជាស៊ូណាត់ មូអឹកកាត់ ជាពិសេសនៅ១០យប់ចុងក្រោយនៃខែនេះ។ រយៈពេលអៀកទីកាហ្វតិចបំផុតគឺ១ម៉ោង ហើយស៊ូណាត់មិនត្រូវឱ្យតិចជាងមួយថ្ងៃមួយយប់នោះទេ។ ស្ត្រីមិនអាចអៀកទីកាហ្វបានទេ លើកលែងតែមានការអនុញ្ញាតពីប្តី។ ស៊ូណាត់ចំពោះអ្នកអៀកទីកាហ្វត្រូវរវល់នឹងការគោរពសក្ការៈនិងការប្រតិបត្តិ ហើយត្រូវកាត់បន្ថយប្រការមួយចំនួនទោះបីច្បាប់អនុញ្ញាត និងត្រូវជៀសវាងពីអ្វីដែលគ្មានបានការសំរាប់ខ្លួនគេ។

# ហាជ្ជ និងអ៊ុំរ៉ោះ

**ចាំបាច់ត្រូវធ្វើហាជ្ជ និងអ៊ុំរ៉ោះឱ្យបានម្តងក្នុងមួយជីវិត។**

**លក្ខខណ្ឌចាំបាច់នៃការធ្វើបុណ្យហាជ្ជ និងអ៊ុំរ៉ោះមាន :**

១. ឥស្លាម ២. មានបញ្ញា ៣. គ្រប់អាយុ(ដឹងក្តី) ៤. មានសិទ្ធិសេរីភាព ៥.មានលទ្ធភាព គឺមានសោហ៊ុយ និងការធ្វើដំណើរ។ ចំណែកឯស្ត្រីត្រូវមានលក្ខខណ្ឌទី៦គឺត្រូវមានម៉ះរ៉ម (មិនអាចការជាមួយគ្នាបានជារៀងរហូត)ទៅជាមួយគាត់ ។ ហាជ្ជរបស់គាត់ក៏ត្រឹមត្រូវដែរដោយគ្មានម៉ះរ៉ាម តែគាត់មានបាប។ ចំពោះអ្នកដែលប្រហែសមិនបានធ្វើរហូតដល់ស្លាប់ គេត្រូវហូតយកទ្រព្យសម្បត្តិរបស់គេទៅធ្វើហាជ្ជី និងអ៊ុំរ៉ោះជំនួសឱ្យអ្នកនោះ។ អ្នកកាហ្វៀរ និងមនុស្សឆ្កួតហាជ្ជរបស់ពួកគេមិនត្រឹមត្រូវនោះទេ។ ចំណែកឯកូនក្មេង និងខ្ញុំបម្រើហាជ្ជគឺត្រឹមត្រូវ តែគេមិនចាត់ទុកហាជ្ជរបស់អ្នកទាំងពីរជាហាជ្ជឥស្លាមនោះទេ។ អ្នកគ្មានលទ្ធភាពដូចជាអ្នកក្រ បើគេខ្ចីទ្រព្យអ្នកដទៃទៅធ្វើហាជ្ជគឺត្រឹមត្រូវ។ អ្នកណាធ្វើហាជ្ជឱ្យអ្នកដទៃ ហើយគេមិនទាន់ធ្វើហាជ្ជសម្រាប់ខ្លួនឯងនោះ ដូច្នេះហាជ្ជដែលគេធ្វើនោះនឹងធ្លាក់បានលើគេដែលជាបុគ្គលធ្វើតែប៉ុណ្ណោះគឺហាជ្ជហ្វីរទូ។

**ការពាក់អៀសរ៉ម:** ស៊ូណាត់ចំពោះអ្នកដែលចង់ពាក់អៀសរ៉ម ត្រូវមុជទឹក សម្អាតខ្លួន លាបទឹកអប់ ដោះឱ្យអស់នូវសម្លៀកបំពាក់ដែលមានថ្នេរ ពាក់សារុង និងក្រណាត់ពណ៌សពីរ បន្ទាប់មកណៀតអៀសរ៉មដោយពោលថា :

( لَبَّيْكَ اللَّهُمَّ عُمْرَةً، أوحَجًّا، أو حجا وعمرة ) បើសិនជាគេមានការព្រួយបារម្ភ គេត្រូវពោលថា ( فَإِنْ حَبَسَنِيْ حَابِسٌ فَمَحِلِّي حَيْثُ حَبَسْتَنِي )

**អ្នកធ្វើហាជ្ជមានរបៀបប្រតិបត្តិ៣សម្រាប់ជ្រើសរើស:**

១. អត្តាម៉ុត្តុក «التمتع» ២. អាល់អ៊ិហ្វរ៉ត «الإفراد» ៣. អាល់គីរ៉ន «القران» ។ ហាជ្ជដែលប្រសើរបំផុតគឺហាជ្ជអត្តាម៉ុត្តុក គឺនៀតកាន់អៀសរ៉មធ្វើអ៊ុំរ៉ោះក្នុងរដូវហាជ្ជរួចចេញពីអ៊ុំរ៉ោះ ហើយនៀតកាន់អៀសរ៉មធ្វើហាជ្ជនៅក្នុងឆ្នាំនោះ។ អាល់អ៊ិហ្វរ៉តគឺណៀតកាន់អៀសរ៉មធ្វើហាជ្ជតែមួយគត់។ ចំណែកឯ អាល់គីរ៉នវិញគឺណៀតកាន់អៀសរ៉មធ្វើទាំងពីរ ឬនៀតអៀសរ៉មធ្វើអ៊ុំរ៉ោះ ក្រោយមកបញ្ចូលហាជ្ជជាមួយនឹងអ៊ុំរ៉ោះមុននឹងចាប់ផ្តើមតវ៉ាហ្វ។

នៅពេលអ្នកដែលចង់ធ្វើហាជ្ជឡើងលើយានជំនិះរួចរាល់ត្រូវសូត្រតាល់ពីយ៉ះថា:

لَبَّيْكَ اللَّهُمَّ لَبَّيْكَ، لَبَّيْكَ لاَشَرِيْكَ لَكَ لَبَّيْكَ، إِنَّ الْحَمْدَ وَالنِّعْمَةَ لَكَ وَالْمُلْكَ، لاَشَرِيْكَ لَكَ.

ស៊ូណាត់សូត្រវាឱ្យបានច្រើន ហើយសូត្រខ្លាំងៗ រីឯស្ត្រីវិញគឺត្រូវសូត្រតិចៗ ឮតែ



ខ្លួនឯងបានហើយ។

**ប្រការដែលគេហាមនៅពេលកាន់អៀសរ៉ម:** ១. កោរសក់ ២. កាត់ក្រចក ៣. ពាក់សម្លៀកបំពាក់មានថ្នេរសម្រាប់បុរស។ លើកលែងតែបើអត់មានសារុង អាចពាក់ខោ ឬបើអត់មានស្បែកជើងផ្ទាត់អាចពាក់ស្បែជើងខ្លួបបាន ហើយមិនត្រូវពិន័យទេ ៤.ពាក់ឈ្នួតក្បាល សម្រាប់បុរស ៥.លាបទឹកអប់នៅលើខ្លួននិងសម្លៀកបំពាក់ ៦.សម្លាប់សត្វប្រមាញ់ តែបើសត្វសាហាវ គេអនុញ្ញាតឱ្យសំលាប់ ៧. ធ្វើចំណងអាពាហ៍ពិពាហ៍ គឺហាំតែមិនត្រូវពិន័យអ្វីទេ ៨.ប៉ះស្ត្រីដោយមានតណ្ហាមិនមែនតាមប្រដាប់ភេទទេ គឺត្រូវពិន័យ សត្វចៀមមួយក្បាល ឬបួសបីថ្ងៃ ឬផ្តល់ចំណីអាហារឱ្យអ្នកក្រីក្រចំនួន៦នាក់ ៩.រួមដំណេកមុននឹងចេញពីតំណមទី ១ «التحلل الأول» គឺហាជ្ជរបស់គេត្រូវខូច ហើយចាំបាច់ធ្វើបំពេញបន្ថែមនិងសងវិញនៅឆ្នាំក្រោយ ជាមួយនឹងការសម្លេះសត្វអូដ្ឋ ហើយចែកឱ្យអ្នកក្រីក្រនៅមឹក្កះ តែបើសិនជាក្រោយពីចេញពីតំណមទី១រួច «التحلل الأول» ហាជ្ជរបស់គេមិនខូចទេតែត្រូវពិន័យសម្លេះសត្វអូដ្ឋមួយក្បាលចែកសាច់ជូនអ្នកក្រនៅមឹក្កះ។បើសិនជារួមដំណេកក្នុងអុំរ៉ោះគឺអុំរ៉ោះនោះត្រូវខូច ហើយត្រូវពិន័យសត្វចៀមមួយក្បាល និងត្រូវធ្វើសងវិញ។ តែក្រៅពីរួមដំណេក មិនធ្វើឱ្យខូចហាជ្ជ និងអុំរ៉ោះនោះទេ។ ស្ត្រីក៏ដូចបុរសដែរតែគេអនុញ្ញាតឱ្យស្ត្រីពាក់សម្លៀកបំពាក់ដែលមានថ្នេរ ហើយមិនត្រូវ ទទូរមុខ ឬពាក់ស្បែមុខ និងស្រោមដៃ។

**ការពិន័យមានពីរ : ១. ជម្រើស** «على التخيير» គឺពិន័យដោយកោរសក់ ឬប្រើទឹកអប់ ឬកាត់ក្រចក ឬពាក់ឈ្នួតក្បាល ឬពាក់សម្លៀកបំពាក់មានថ្នេរសម្រាប់បុរស។ គេផ្តល់ជម្រើសជាមួយនឹងការបួសបីថ្ងៃ ឬផ្តល់ចំណីអាហារឱ្យអ្នកក្រចំនួន៦នាក់។ សម្រាប់អ្នកក្រម្នាក់ឱ្យកន្លះសក(គឺមួយគីឡូកន្លះ) ឬសម្លេះសត្វចៀមមួយក្បាល។ ចំពោះការប្រមាញ់សត្វវិញត្រូវសងដូចសត្វណាដែលគេបានប្រមាញ់ បើសិនជាមាន បើគ្មានទេ ត្រូវចេញជាលុយស្មើនឹងតម្លៃសត្វនោះ។

**២. តាមលំដាប់លំដោយ** «على الترتيب» ពិន័យចំពោះអ្នកធ្វើហាជ្ជអ័ត្តាម៉ុត្តុក និងហាជ្ជគីរ៉នត្រូវពិន័យជាសត្វចៀម ហើយពិន័យចំពោះការរួមដំណេកគឺសត្វអូដ្ឋ បើអត់មានត្រូវបួសបីថ្ងៃនៅពេលធ្វើហាជ្ជ ហើយបួសប្រាំពីរថ្ងៃនៅពេលត្រលប់មកវិញ។ ការសម្លេះសត្វ ឬបរិច្ចាគចំណីអាហារគឺសម្រាប់អ្នកក្រីក្រនៅមឹក្កះ។

**ចូលទឹកដីមឹក្កះ:** នៅពេលអ្នកធ្វើហាជ្ជចូលម៉ាស្ជិតហារ៉ាម ត្រូវសូត្រទូអានៅពេលចូល ម៉ាស្ជិត បន្ទាប់មកចាប់ផ្តើមតវ៉ាហ្វអុំរ៉ោះ បើធ្វើហាជ្ជអ័ត្តាម៉ុត្តុក ឬតវ៉ាហ្វ

ស្វាគមន៍ ឬគេហៅថា តវ៉ាហ្វកូទូម «طواف القدوم» បើសិនជាធ្វើហាជ្ជអ៊ិហ្វរ៉ត ឬគីរ៉ន ត្រូវពាក់ក្រណាត់ ដោយព័ទ្ធ ពីក្រោមស្មាស្តាំ ហើយដាយទាំងសងខាងព័ទ្ធពីលើស្មាខាងឆ្វេងរបស់គេ។ គេចាប់ផ្តើមតវ៉ាហ្វនៅត្រង់ថ្មខ្មៅ «الحجرالأسود» កាន់ថ្មខ្មៅនោះ និងថើបវា ឬធ្វើជាសញ្ញា ហើយសូត្រថា «بسم الله، الله أكبر» ត្រូវធ្វើបែបនេះគ្រប់ជុំទាំងអស់។ ត្រូវដាក់កឹកហ្ពះនៅខាងឆ្វេងដៃ ហើយតវ៉ាហ្វប្រាំពីរជុំ ដើរឱ្យញាប់(ញាប់បន្តិច និងបោះជំហានខ្លីៗ)នៅបីជុំដំបូងតាមលទ្ធភាព។ ចំពោះជុំដែលនៅសេសសល់ត្រូវដើរធម្មតា។ នៅពេលទៅដល់ជិតជ្រុងយ៉ាម៉ានី «الركن اليماني» ត្រូវកាន់ជ្រុងនោះ បើសិនជាអាចទៅដល់។ នៅចន្លោះជ្រុងទាំងពីរត្រូវសូត្រថា «ربنا آتنا في الدنيا حسنة وفي الآخرة حسنة وقنا عذاب النار» ហើយគ្រប់ជុំទាំងអស់ត្រូវសុំទូអាតាមតែចិត្តប្រាថ្នាចង់បាន។ បន្ទាប់មកទៀត បើសិនជាអាចគឺត្រូវសឡាតពីរ រ៉ឹកអាត់នៅក្រោយម៉ាកម «المقام» ។ក្នុងពីររ៉ឹកអាត់នេះសូត្រសូរ៉ោះអាល់កាហ្វីរ៉ូន «الكافرون» និងអាល់អៀខឡើស «الإخلاص»។ បន្ទាប់មកផឹកទឹកហ្សាំហ្សាំឱ្យច្រើន រួចត្រលប់ទៅកាន់ថ្មខ្មៅវិញ កាន់ឬពាល់វា បើសិនជាអាច។ បន្ទាប់មកទូអានៅពេលបិតនៅ(ចន្លោះរវាងថ្មខ្មៅ និងទ្វារកឹកហ្ពះ) រួចចេញដំណើរទៅកាន់ សហ្វា«الصفا» ឡើងទៅលើ ហើយសូត្រថា «أَبْدَأُ بِمَا بَدَأَ اللهُ بِهِ» រួចសូត្របន្ទូលរបស់អល់ឡោះថា

﴿إِنَّ ٱلصَّفَا وَٱلْمَرْوَةَ مِن شَعَآئِرِ ٱللَّهِ فَمَنْ حَجَّ ٱلْبَيْتَ أَوِ ٱعْتَمَرَ فَلَا جُنَاحَ عَلَيْهِ أَن يَطَّوَّفَ بِهِمَا وَمَن تَطَوَّعَ خَيْرًا فَإِنَّ ٱللَّهَ شَاكِرٌ عَلِيمٌ﴾

មានន័យថា«ជាការពិតណាស់ភ្នំសហ្វា និងភ្នំម៉ារវ៉ះគឺជាផ្នែកមួយនៃអត្តសញ្ញាណសាសនារបស់អល់ឡោះ។ ដូច្នេះ ចំពោះអ្នកដែលធ្វើហាជ្ជ ឬអ៊ុំរ៉ោះនៅវិហារកឹកហ្ពះ គឺគ្មានកំហុសអ្វីទេ បើគេធ្វើសាអ៊ីរវាងភ្នំទាំងពីរនេះ។ ចំពោះអ្នកដែលស្ម័គ្រចិត្តធ្វើអំពើល្អ ពិតប្រាកដណាស់អល់ឡោះមហាដឹងគុណ មហាដឹង»។ (អាល់ហ្គោគ៉ោះ : ១៥៨)

**សូត្រតឹកពៀរ និងតះលីល តម្រង់ទៅកាន់**

គីបឡ័ត ហើយលើកដៃទាំងពីររួចសុំទូអា រួចហើយចុះមកវិញចុះដោយដើរសំដៅទៅកាន់ភ្លើងសញ្ញាពណ៌បៃតង «العلم الأخضر» រួចហើយប្រញាប់ទៅកាន់ភ្លើងសញ្ញាផ្សេងទៀត «العلم الآخر» ក្រោយមកបន្តដំណើររហូតដល់ម៉ារវ៉ះ ហើយត្រូវធ្វើដូចដែលគេធ្វើនៅលើភ្នំសហ្វាដែរ។ រួចហើយចុះមកវិញ ត្រូវធ្វើដូចដែលបានធ្វើនៅជុំទីមួយដែររហូតដល់គ្រប់ប្រាំពីរជុំ។ ពីសហ្វាទៅកាន់ម៉ារវ៉ាស១ជុំ ហើយពីម៉ារវ៉ះទៅកាន់សហ្វាគឺ១ជុំទៀត ហើយធ្វើបែបនេះ។ បន្ទាប់មកត្រូវកាត់សក់ ឬ



កោរសក់ តែកោរសក់ល្អជាង លើកលែងតែធ្វើអុំរ៉ោះអ័ត្តាមុ័ត្តក ពីព្រោះគេនឹងធ្វើហាជ្ជបន្ទាប់ពីអុំរ៉ោះរួច។ ចំណែកឯហាជ្ជគីរ៉ន និងអីហ្វរ៉តគឺគេមិនទាន់អនុញ្ញាទេបន្ទាប់ពីតវ៉ាហ្វស្វាគមន៍ (طواف القدوم) រហូតដល់គប់គោលនៅថ្ងៃរ៉យ៉ា (ដាំរ៉តុលអាកពះ)។ ស្ត្រីក៏ដូចបុរសដែរ គ្រាន់តែស្ត្រីមិនត្រូវដើរលឿនទេនៅពេលតវ៉ាហ្វ និងសាអ៊ី។ **លក្ខណៈធ្វើបុណ្យហាជ្ជ :** នៅថ្ងៃអាត់តើរវីយ៉ះ «التروية» ជាថ្ងៃទីប្រាំបីត្រូវនៀតកាន់អៀសរ៉ម បើសិនជាផ្ទះរបស់គេនៅក្នុងទឹកដីមឹក្កះ ហើយគេធ្វើដំណើរទៅកាន់មីណាដើម្បីដេកនៅទីនោះនៅយប់ទីប្រាំបួន។ នៅពេលព្រឹកថ្ងៃរះនៃថ្ងៃទីប្រាំបួនត្រូវធ្វើដំណើរទៅកាន់អារ៉ហ្វះ។លុះថ្ងៃទ្រេតសឡាតហ្សូហ្ជរ រួមជាមួយនឹងអាសើរដោយកសើរ (បង្រួម) ហើយនៅអារ៉ហ្វះទាំងមូលជាកន្លែងសម្រាប់ស្នាក់នៅ លើកលែងតែជ្រលង (អូរ៉ណាស់)។ ត្រូវសូត្រឱ្យបានច្រើននូវ : «لا إله إلا الله وحده لاشريك له،له الملك وله الحمد وهو على كل شيئ قدير» ត្រូវខំប្រឹងទូអា និងតារហ្គាត់ និងពេញចិត្តប្រតិបត្តិចំពោះអល់ឡោះ។ នៅពេលថ្ងៃលិចធ្វើដំណើរទៅកាន់មុសដាលីហ្វះ «مزدلفة» ដោយចិត្តនឹងនរ និងស្ងប់ស្ងៀមដោយសូត្រតាល់ពីយ៉ះ និងហ្សីកៀរ។ នៅពេលទៅដល់មុសដាលីហ្វះ «مزدلفة» ត្រូវសឡាតម៉ាហ្រិប រួមជាមួយនឹងអ៊ីស្សាដោយកសើរ រួចហើយដេកនៅទីនោះ។ បន្ទាប់មកសឡាតសូហ្គោះឱ្យទាន់ពេល ហើយអង្គុយនៅទីនោះដោយសុំទូអារហូតដល់មេឃភ្លឺស្រឡះ ហើយត្រូវចេញដំណើរមុនថ្ងៃរះ នៅពេលទៅដល់ជ្រលង វ៉ាទីមូហើសសើរ «واد محسر» បើសិនជាអាចត្រូវដើរលឿនបន្តិច រហូតដល់មីណា ហើយចាប់ផ្តើមគប់គោលនៅចាំរ៉ោះអាកហ្គះ «جمرة العقبة» ចំនួនប្រាំពីរដុំក្រួសតូចៗប៉ុនគ្រាប់សណ្តែក។ រាល់ការគប់គ្រាប់ក្រួសនីមួយៗត្រូវសូត្រតឹកពៀរលើកដៃទាំងពីរនៅពេលគប់។ លក្ខខណ្ឌត្រូវឱ្យគ្រាប់ក្រួសធ្លាក់ក្នុងអាងនោះ ទោះបីជាដុំថ្មនោះមិនប៉ះនឹងបង្គោលនោះក៏ដោយ។ ត្រូវឈប់សូត្រ តាលពីយ៉ះនៅពេលចាប់ផ្តើមគប់ រួចហើយសម្លេះសត្វ ក្រោយមកត្រូវកោរសក់ ឬកាត់សក់ តែកោរសក់ល្អជាងកាត់។ នៅពេលគប់គោល គេអាចធ្វើអ្វីបានគ្រប់យ៉ាងលើកលែងតែស្ត្រី ហើយនេះគឺជាការចេញពីតំណមទី១ «التحلل الأول»។ បន្ទាប់មកបន្តដំណើរមកកាន់មឹក្កះ ហើយតវ៉ាហ្វអ៊ីហ្វាហ្គោះ គឺតវ៉ាហ្វវ៉ាជិបដើម្បីបង្គ្រប់កម្មវិធីហាជ្ជ។ បន្ទាប់មកធ្វើសាអ៊ីរវាងសហ្វានិងម៉ារវ៉ះ បើសិនជាហាជ្ជអាល់មូតាមុ័ត្តក ឬមិនទាន់ធ្វើសាអ៊ីជាមួយនឹងតវ៉ាហ្វកូទូម។ បើសិនជាគេបានធ្វើដូច្នោះគឺគេអនុញ្ញាតឱ្យធ្វើអ្វីគ្រប់បែបយ៉ាងសូម្បីតែស្ត្រី នេះគឺជាការចេញពីតំណមទី២ «التحلل الثاني» បន្ទាប់មកត្រលប់ទៅមី




ណា ហើយដេកឱ្យគ្រប់ចំនួនយប់នៅទីនោះគឺវ៉ាជិប។ គប់គោលបន្ទាប់ពីថ្ងៃទ្រេត នៅគោលនីមួយៗចំនួនប្រាំពីរដុំក្រួស ចាប់ផ្តើមពីគោលទីមួយ គប់វាចំនួនប្រាំពីរដុំ បន្ទាប់មកបន្តដំណើរទៅមុខបន្តិច ហើយឈរសុំទូអាពីអល់ឡោះ។ ពេលទៅដល់គោលកណ្តាល ត្រូវគប់វាចំនួនប្រាំពីរដុំក្រួស ហើយសុំទូអា។ បន្ទាប់ពីគប់គោលអាកហ្ពះហើយមិនត្រូវឈប់នៅទីនោះទេ។ នៅថ្ងៃទីពីរគប់ដូចគ្នាដែរ បើសិនជាចង់ចេញដំណើរចូរចាកចេញមុនថ្ងៃលិច។ តែបើសិនជាថ្ងៃលិចនៅថ្ងៃទី១២នៅមីណាគេចាំបាច់ត្រូវតែដេកនៅទីនោះ និងគប់គោលនៅថ្ងៃស្អែក លើកលែងតែក្នុងករណីចង្អៀត ហើយគេប្តេជ្ញាចិត្តចេញ គឺគ្មានបញ្ហាអ្វីទេ ទោះបីជាក្រោយពេលថ្ងៃលិច។ ចំណែកឯហាជ្ជគីរ៉ននក៏ដូចអ៊ីហ្វរ៉ាតដែរ គ្រាន់តែគេត្រូវសម្លេះសត្វដូចជាអ័ត្តាម៉ុត្តកដែរ។ បើសិនជាគេចង់វិលត្រឡប់ទៅរកក្រុមគ្រួសាររបស់គេវិញ គឺគេមិនអាចចេញទៅបានទេ លុះត្រាតែគេទៅតវ៉ាហ្វលានៅវិហារពៃតុលឡោះសិន ព្រោះជាពេលវេលាចុងក្រោយបង្អស់របស់គេនៅពៃតុលឡោះ។ លើកលែងតែស្ត្រីដែលមានរដូវ និងឈាមឆ្លងទន្លេគឺគេពុំត្រូវតវ៉ាហ្វលានោះទេ។ បើសិនជាគេធ្វើជំនួញបន្ទាប់ពីតវ៉ាហ្វ គេត្រូវត្រលប់មកតវ៉ាហ្វម្តងទៀត។ ចំពោះអ្នកដែលចេញមុនតវ៉ាហ្វលាចាំបាច់ត្រូវត្រលប់មកវិញ បើសិនជានៅជិត តែបើនៅឆ្ងាយគេត្រូវសម្លេះសត្វ។

<u>**រូកុនហាជ្ជមានបួន**</u> **១.** អាល់អៀសរ៉ម គឺនៀតចូលពិធីហាជ្ជ។
**២.**ឈប់សម្រាកនៅទីភ្នំអារ៉ហ្វះ។ **៣.**តវ៉ាហ្វ (អ៊ីហ្វាហ្វោះ)។ **៤.**ធ្វើសាអ៊ីហាជ្ជ។

<u>**វ៉ាជិបហាជ្ជមានប្រាំបីគឺ:**</u>

**១.**នៀតកាន់អៀសរ៉មនៅមីកត។ **២.**ឈប់នៅអារ៉ហ្វះរហូតដល់យប់។ **៣.**ដេកសម្រាកនៅមុសដាលីហ្វះរហូតដល់រំលងអធ្រាត្រ។ **៤.**ដេកសម្រាកនៅមីណាប៉ុន្មានយប់ក្នុងថ្ងៃតើសរីក។ **៥.**គប់គោល។ **៦.**កោរសក់ ឬកាត់សក់។
**៧.** តវ៉ាហ្វលាដំណើរ។ **8.**សម្លេះសត្វសម្រាប់អាល់មូតាម៉ត្តិក និងគីរ៉ន។

**រូកុនអ៊ុំរ៉ោះមានបី** : **១.** អៀសរ៉ម។ **២.** តវ៉ាហ្វអ៊ុំរ៉ោះ។ **៣.** ធ្វើសាអ៊ីអ៊ុំរ៉ោះ។
**វ៉ាជិបអ៊ុំរ៉ោះមានពីរ** : **១.**អៀសរ៉មពីមីកត។ **២.**កោរសក់ ឬកាត់សក់។

❖ ចំពោះអ្នកដែលបោះបង់រូកុនណាមួយ ពិធីអ៊ីហ្វាហ្វាត់ហាជ្ជមិនគ្រប់លក្ខណៈទេ លើកលែងតែមានរូកុននេះ។ ចំពោះអ្នកដែលបោះបង់ប្រការវ៉ាជិប ត្រូវពិន័យដោយសម្លេះសត្វ។ រីឯអ្នកដែលបោះបង់ស៊ុណាត់ គឺគេពុំត្រូវធ្វើអ្វីទាំងអស់។

**លក្ខខណ្ឌដែលធ្វើឱ្យតវ៉ាហ្វនៅក័កហ្ពះត្រឹមត្រូវមាន១៣:**

**១.**ឥស្លាម។ **២.** មានបញ្ញា។ **៣.**នៀតដាក់លាក់មួយ។ **៤.**ដល់ម៉ោងតវ៉ាហ្វ។





**៥.**បិទបាំងកេរ្ដិ៍ខ្មាសតាមលទ្ធភាព។ **៦.**ស្អាតស្អំពីហាទីសពុំមែនសម្រាប់ក្មេងទេ។ **៧.**តវ៉ាហ្វគ្រប់ប្រាំពីរជុំដោយប្រាកដ។ **៨.**ដាក់កក់ហ្ពះនៅខាងឆ្វេងខ្លួនឯង ត្រូវធ្វើឡើងវិញ បើសិនជាមានកំហុសក្នុងការតវ៉ាហ្វ។ **៩.**ពុំត្រូវត្រលប់ក្រោយវិញ ដោយដើរ។ **១០.**ដើរចំពោះអ្នកដែលមានលទ្ធភាព។ **១១.**ធ្វើបន្តបន្ទាប់រវាងជុំនីមួយៗ។ **១២.**បិតនៅក្នុងបរិវេណម៉ាស្ជិតហារ៉ម។ **១៣.**ចាប់ផ្ដើមតវ៉ាហ្វនៅត្រង់ថ្មខ្មៅ។

**សូណាត់នៅពេលតវ៉ាហ្វ៖ កាន់ និងពាល់ថ្មខ្មៅ** ថើបវា តឹកពៀរនៅក្បែរវា កាន់ជ្រុងយ៉ាម៉ានី ពាក់អៀសរ៉មេព័ទ្ធខ្លួន ដើរញាប់ជើង និងដើរធម្មតាតាមកន្លែងដែលត្រូវដើរធម្មតា ទូអានិងហ្ស៊ីកៀរនៅពេលតវ៉ាហ្វ ទៅក្បែរពៃតុលឡោះ និងសឡាតពីររ៉ឹកអាត់នៅក្រោយម៉ាកម។

<u>**លក្ខខណ្ឌសាអ៊ីមានប្រាំបួន ៖**</u> **១.**ឥស្លាម។ **២.**មានស្មារតីល្អ។ **៣.**នៀត។ **៤.**បន្តបន្ទាប់។ **៥.**ដើរសម្រាប់អ្នកដែលមានលទ្ធភាព **៦.**គ្រប់ប្រាំពីរជុំ **៧.**សាអ៊ីចុះឡើងលើភ្នំសហ្វា និងម៉ារវ៉ះ។ **៨.**ធ្វើបន្ទាប់ពីតវ៉ាហ្វបានត្រឹមត្រូវ។ **៩.**ផ្ដើមដោយចំនួនសេសពីភ្នំសហ្វា និងចំនួនគូពីភ្នំម៉ារវ៉ះ។

**សូណាត់ធ្វើសាអ៊ី៖** ជ្រះស្អាតពីហាទីស និងភាពកខ្វក់ បិទបាំងកេរ្ដិ៍ខ្មាស ហ្ស៊ីកៀរ និងទូអានៅពេលកំពុងធ្វើសាអ៊ី ដើរលឿន និងដើរធម្មតាតាមកន្លែងរបស់វា សាអ៊ីចុះឡើងលើភ្នំសហ្វានិងម៉ារវ៉ះ ត្រូវធ្វើបន្តបន្ទាប់គ្នារវាងសាអ៊ីនិងតវ៉ាហ្វ។

**កំណត់សម្គាល់៖** ជាការប្រសើរបំផុតគឺគប់គោលក្នុងថ្ងៃតែមួយ តែបើពន្យាររហូតដល់ថ្ងៃស្អែក ឬដល់ថ្ងៃចុងក្រោយនៃថ្ងៃតើសរិកក៏គេអនុញ្ញាតដែរ។

**សំឡេះសត្វធ្វើគួរហ្ពាន៖** សូណាត់មូអ៊ឹក្កាត «مؤكدة»។ នៅពេលចូលដល់ថ្ងៃទី១០ ហ្ស៊ុលហាជ្ជះ គេហាមចំពោះអ្នកដែលចង់សម្លេះសត្វធ្វើគួរហ្ពាន មិនកាត់សក់ក្រចក និងស្បែករបស់គេរហូតដល់គេសម្លេះរួច។

**អាគីកោះ៖** សុណ្ណះ។ សម្រាប់កូនប្រុសសម្លេះសត្វចៀម២ក្បាល ក្មេងស្រីសត្វចៀម១ក្បាល។ គេសម្លេះនៅក្រោយកើតបានប្រាំពីរថ្ងៃ។ នៅថ្ងៃទីប្រាំពីរនោះដែរ សូណាត់ឱ្យកោរសក់កូន ហើយបរិច្ចាគប្រាក់ទម្ងន់ស្មើនឹងសក់នោះ គេដាក់ឈ្មោះឱ្យវា ហើយឈ្មោះដែលប្រសើរបំផុតគឺ (عبدالله عبدالرحمن) គេហាមដាក់ឈ្មោះអាប់ឌុជាមួយនឹងពាក្យផ្សេងក្រៅពីឈ្មោះរបស់អល់ឡោះដូចជា អាប់ឌុនណាពី និងអាប់ឌុរ៉ស៊ូល។ បើសិនជាពេលវេលាធ្វើអាគីកោះស្របគ្នាជាមួយនឹងពេលធ្វើគួរហ្ពាន អាចធ្វើបានមួយណាក៏បាន ហើយគេអនុញ្ញាតទាំងពីរ។

## សង្ខេបការធ្វើហាជ្ជ ៖

<table>
<tr><th>ពិធី</th><th>អ័ត្តាម៉ុត្តក</th><th>អាល់គីរ៉ន</th><th>អាល់អ៊ិហ្វ្រ៉ត</th></tr>
<tr><td>ចាប់ផ្តើមអៀសរ៉មនិងតាល់ពីយ៉ះ</td><td>لبيك عمرة متمتعا بها إلى الحج</td><td>لبيك عمرة وحجا</td><td>لبيك حجا</td></tr>
<tr><td>បន្ទាប់</td><td>តវ៉ាហ្វ អ៊ុំរ៉ោះ</td><td>តវ៉ាហ្វកួទូម</td><td>តវ៉ាហ្វ កួទូម</td></tr>
<tr><td>បន្ទាប់</td><td>សាអ៊ី អ៊ុំរ៉ោះ</td><td>សាអ៊ី ហាជ្ជ</td><td>សាអ៊ី ហាជ្ជ</td></tr>
<tr><td>បន្ទាប់</td><td>កាក់សក់ តាហ័ល្លលពេញលេញ</td><td>រក្សាអៀសរ៉មរបស់គេ</td><td>រក្សាអៀសរ៉មរបស់គេ</td></tr>
<tr><td>ថ្ងៃទី៨មុនហ្សូហ្ស</td><td>នៀតអៀសរ៉មហាជ្ជនៅមឹក្កះរួចទៅមីណា</td><td>ទៅមីណា</td><td>ទៅមីណា</td></tr>
<tr><td>ថ្ងៃទី៩ ក្រោយថ្ងៃរះ</td><td colspan="3">ទៅអារ៉ហ្វះ សឡាតហ្ស៊ូហ្ស៊ូរនិងអាសើរចាមក់កសើរ ចាមក់តឹកទីមរួចទុកពេលទូអារហូតដល់ថ្ងៃលិច</td></tr>
<tr><td>ក្រោយថ្ងៃលិច</td><td colspan="3">ទៅមុសដាលីហ្វះ សឡាតម៉ាហ្រិប និងអ៊ីសា ចាមក់កសើរពេលទៅដល់ និងដេកនៅទីនោះរហូតដល់ពាក់កណ្តាលយប់និងសូណាត់ត្រៀមខ្លួនសម្រាប់សឡាតហ្វាជើរ</td></tr>
<tr><td rowspan="4">ថ្ងៃសម្លេះ (ថ្ងៃបុណ្យ) បន្ទាប់ពីអារុណមុននឹងថ្ងៃរះ</td><td colspan="3">ទៅមីណា និងគប់គោលអាកហ្ពះ</td></tr>
<tr><td>សម្លេះសត្វ</td><td>សម្លេះសត្វ</td><td>———</td></tr>
<tr><td colspan="3">កោរឬកាត់សក់ រួចតវ៉ាហ្វអ៊ីហ្វាហ្វោះធ្វើបានពីរក្នុងចំណោមបីនេះបានតាហ័ល្លលទី១ ហើយធ្វើបានទាំងបី គឺបានតាហ័ល្លលទី២</td></tr>
<tr><td>សាអ៊ីហាជ្ជ</td><td>———</td><td>———</td></tr>
<tr><td>ថ្ងៃទី១១.១២.១៣ សម្រាប់អ្នកពន្យារ</td><td colspan="3">គប់គោលតូច កណ្តាល និងគោលធំ ក្រោយពេលថ្ងៃទ្រេត</td></tr>
<tr><td>ពេលចេញដំណើរ</td><td colspan="3">តវ៉ាហ្វលាដំណើរ ស្ត្រីមករដូវ និងឆ្លងទន្លេមិនបាច់តវ៉ាហ្វទេ</td></tr>
</table>

# ប្រយោជន៍ផ្សេងៗ

សៃត្វនចង់យកឈ្នះមនុស្សដោយប្រើឧបាយកលមួយក្នុងចំណោមឧបាយកលទាំងប្រាំពីរ បើឧបាយកលណាមួយបរាជ័យ វាប្តូរឧបាយកលផ្សេងទៀត។ គឺឧបាយកលធ្វើឱ្យស៊ីរិក និងគូហ្វរ។ បើអត់មានលទ្ធភាព ចាប់ផ្តើមដោយការបង្កើតថ្មីនៅក្នុងគោលជំនឿ និងបោះបង់ការធ្វើតាមគំរូណាពី និងសហាហ្ពាត់របស់គាត់ បើអត់មានលទ្ធភាពទៀត ចាប់ផ្តើមដោយធ្វើអំពើបាបធំ បើអត់មានលទ្ធភាពទៀតឱ្យប្រព្រឹត្តអំពើបាបតូច បើអត់មានលទ្ធភាពទៀត ចាប់ផ្តើមដោយឱ្យបង្កើនការធ្វើអំពើហារូសឱ្យបានច្រើន បើអត់មានលទ្ធភាពទៀត ចាប់ផ្តើមដោយឱ្យប្រតិបត្តិប្រការផ្សេងល្អប្រសើរជាង និងទទួលបានផលបុណ្យច្រើនជាង។

**អំពើអាក្រក់:** គេអាចលាងជម្រះអំពើនេះដោយប្រការជាច្រើនដូចជា សារភាពទោសកំហុសដោយចិត្តស្មោះត្រង់ សុំការអភ័យទោសពីអល់ឡោះ ធ្វើអំពើកុសល ត្រូវទទួលរងគ្រោះ ការបរិច្ចាគ ទូអារបស់អ្នកដទៃ។ បើសិនជានៅសេសសល់ ហើយអល់ឡោះមិនទាន់អភ័យទោសគឺគេនឹងទទួលទារុណកម្មនៅក្នុងផ្នូរ ឬនៅថ្ងៃគីយ៉ាម៉ាត់ ឬនៅក្នុងឋាននរកហូតដល់ជ្រះស្អាតពីអំពើអាក្រក់នោះ។ បន្ទាប់មក គេចូលឋានសួគ៌ បើសិនជាគេស្លាប់ក្នុងជំនឿតាវហេត។ ក៏ប៉ុន្តែ បើសិនជាគេស្លាប់ក្នុងភាពគ្មានជំនឿ ឬស៊ីរិក ឬមូណាហ្វិកគឺគេចុះនរកជារៀងរហូត។

**បទល្មើស និងអំពើបាបមានឥទ្ធពលអាក្រក់ខ្លាំងចំពោះមនុស្ស ដូចជា:** ឥទ្ធិពលអាក្រក់លើដួងចិត្ត : បន្សល់ភាពឯកោ និងងងឹតអន្ធការ អាប់ឱន ឈឺ និងឃាឃាំងរូបគេពីអល់ឡោះជាម្ចាស់។

**ចំពោះសាសនា:** បន្សល់នូវអំពើអាក្រក់នេះវិញដដែល រារាំងខ្លួនពីការប្រតិបត្តិរារាំងខ្លួនពីការសុំទូអារបស់អ្នកនាំសាររបស់អល់ឡោះ ពួកទេវតា និងពួកអ្នកមានជំនឿ។ **ចំពោះរិហ្សគី :** អំពើនេះរារាំងរិហ្សគី បាត់បង់ពរជ័យ និងវិនាសទ្រព្យសម្បត្តិ។ **ចំពោះបុគ្គល :** ជីវិតគ្មានពរជ័យ បន្សល់នូវជីវិតរស់នៅងងឹងងឹតអន្ធការ និងទទួលរងឧបសគ្គគ្រប់កិច្ចការក្នុងជីវិត។

**ចំពោះអំពើល្អ:** រារាំងចំពោះការទទួលយកអំពើល្អ។

**ចំពោះសង្គម:** បាត់បង់ស្ថេរភាពសង្គម ទំនិញឡើងថ្លៃ
ការជិះជាន់ធ្វើបាបពីសំណាក់អ្នកមានអំណាច និងសត្រូវ ធ្វើឱ្យរាំងភ្លៀង។ល។

**ទុក្ខកង្វល់:** ភាពរីករាយ ស្រស់ស្រាយ និងសេចក្តីសុខក្នុងចិត្ត និងភាពអស់ទុក្ខកង្វល់គឺសេចក្តីប្រាថ្នាចង់បាននៃបុគ្គលគ្រប់រូប។ ដើម្បីទទួលបានបែបនេះ




មានមូលហេតុជាច្រើនផ្នែកសាសនា ធម្មជាតិ និងការអនុវត្ត។ កត្តាទាំងនេះគ្មានសម្រាប់អ្នកណាក្រៅពីអ្នកមានជំនឿឡើយមូលហេតុទាំងនោះមានដូចជា ១.មានជំនឿចំពោះអល់ឡោះ។ ២.ប្រតិបត្តិប្រការដែលគេបង្គាប់ប្រើ និងជៀសវាងពីប្រការដែលគេហាមឃាត់។ ៣.ប្រតិបត្តិអំពើកុសលធម៌ចំពោះសត្វលោកទាំងពាក្យសម្តី និងកាយវិការ និងអំពើល្អផ្សេងៗទៀត។ ៤.ខំប្រតិបត្តិអំពើល្អ ឬរៀនចំណេះដឹងដែលមានប្រយោជន៍ទាំងផ្នែកសាសនា និងលោកីយ៍។ ៥.មិនត្រូវខ្វល់ខ្វាយពីកិច្ចការអនាគត និងអតីតកាលកន្លងផុត តែត្រូវយកចិត្តទុកដាក់ចំពោះកិច្ចការបច្ចុប្បន្ន។ ៦.ហ្ស៊ីកៀរចំពោះអល់ឡោះឱ្យបានច្រើន ៧.និយាយដឹងគុណពីពរជ័យរបស់អល់ឡោះទាំងខាងក្រៅ និងខាងក្នុង។ ៨.សម្លឹងមើលអ្នកដែលមានកម្រិតជីវភាពទាបជាង មិនត្រូវសម្លឹងមើលអ្នកមានកម្រិតខ្ពស់ជាងនៃផ្នែកលោកីយ៍។ ៩.ព្យាយាមលុបបំបាត់នូវរាល់កត្តាទាំងឡាយដែលនាំឱ្យកើតទុក្ខកង្វល់ ហើយត្រូវស្វែងរកហេតុផលទាំងឡាយដែលនាំមកនូវសេចក្តីសុខ។ ១០.វិលត្រលប់ទៅជ្រកកោនជាមួយនឹងអល់ឡោះដោយការទូអាសុំនានាដើម្បីលុបបំបាត់ទុក្ខកង្វល់។គ្មានបុគ្គលណាមួយជួបនឹងវិប័ត្តទុក្ខព្រួយហើយទូអាថាៈ មានន័យថា «**ឱអល់ឡោះជាម្ចាស់! ប្រាកដណាស់ខ្ញុំជាខ្ញុំបម្រើរបស់ទ្រង់ និងជាកូននៃខ្ញុំបម្រើរបស់ទ្រង់ (ណាពីអាដាំ) ជាកូននៃស្ត្រីខ្ញុំបម្រើរបស់ទ្រង់(ហាវ៉ា)។ រូបខ្ញុំស្ថិតក្នុងកណ្តាប់ដៃរបស់ទ្រង់។ បទបញ្ជារបស់ទ្រង់មកលើខ្ញុំត្រូវបានអនុវត្តការកំណត់របស់ទ្រង់យុត្តិធម៌សម្រាប់ខ្ញុំ។ ខ្ញុំសុំពីទ្រង់តាមរយៈព្រះនាមទាំងឡាយដែលជារបស់ទ្រង់ ទ្រង់បានប្រទាននាមដោយព្រះអង្គឯង ឬទ្រង់បានបញ្ចុះមកក្នុងគម្ពីររបស់ទ្រង់ ឬក៏ទ្រង់បានបង្រៀននរណាម្នាក់ក្នុងចំណោមខ្ញុំរបស់ទ្រង់ ឬក៏នាមដែលទ្រង់បានថែរក្សាវាទុកដោយការដឹងនូវរឿងអាថ៌កំបាំងដែលទ្រង់មាន(តាមរយៈនាមទាំងនេះ)។ ខ្ញុំសុំពីទ្រង់ឱ្យអាល់គួរអានក្លាយជាភាពស្រស់ថ្លានៃបេះដូងនៃបេះដូងរបស់ខ្ញុំ ជារស្មីនៃទ្រូងរបស់ខ្ញុំ ជាការបំបាត់នៃទុក្ខព្រួយរបស់ខ្ញុំ និងជាការឃ្លាតឆ្ងាយនៃការព្រួយបារម្ភរបស់ខ្ញុំ**»
លើកលែងតែអល់ឡោះជាអ្នកបំបាត់ទុក្ខព្រួយរបស់គេហើយទ្រង់ជាអ្នកផ្លាស់ប្តូរភាពទុក្ខព្រួយទៅជាភាពសប្បាយរីករាយ។ ទូអានេះធ្វើឱ្យបាត់ទុក្ខកង្វល់ ភាពខ្វាយខ្វល់ ហើយជំនួសមកវិញនូវភាពសប្បាយរីករាយ។**លោកអ៊ីព្រហ៊ីមអាល់ខាវវើសបាននិយាយថា ថ្នាំព្យាបាលដួងចិត្តមានប្រាំយ៉ាង:** សូត្រគួរអានដោយត្រិះរិះពិចារណា។ ធ្វើឱ្យពោះទទេគ្មានចំណីអាហារ។ សឡាតពេលយប់។ សុំទូអានៅពេលទៀបភ្លឺ។ និងរាប់អានមិត្តភ័ក្តិដែលប្រកាន់នូវកុសលធម៌។



**ការរៀបការ:** សូណាត់ឱ្យរៀបការចំពោះអ្នកដែលមានតណ្ហាតែមិនខ្លាចធ្លាក់ខ្លួនក្នុងអំពើហ្ស៊ីណាហើយគេអនុញ្ញាតចំពោះអ្នកដែលគ្មានតណ្ហា តែវ៉ាជិបចំពោះអ្នកដែលខ្លាចខ្លួនទៅប្រព្រឹត្តអំពើហ្ស៊ីណា។ ត្រូវរៀបការមុននឹងធ្វើហាជ្ជវ៉ាជិប។ ហារ៉ាមមើលស្ត្រី មើលដោយតណ្ហាចំពោះស្ត្រីពេញវ័យ ឬ ជំទង់ នៅជាមួយគ្នាស្ងាត់ៗ និងមើលសត្វពាហនៈដោយតណ្ហា។ ឪពុកម្តាយមិនអាចបង្ខំកូនប្រុសឱ្យរៀបការជាមួយអ្នកដែលគេមិនស្រលាញ់។ កូនមិនត្រូវធ្វើតាមឪពុកម្តាយក្នុងរឿងនេះ ហើយរឿងរើសគូស្រករមិនមែនជាអំពើអកត្តញ្ញូនោះទេ។

**លក្ខខណ្ឌនៃការរៀបការ:** ១.ការកំណត់គូស្រករ។ ការរៀបការពុំទាន់ត្រឹមត្រូវទេ បើសិនជាអាណាព្យាបាលនិយាយថា ខ្ញុំរៀបការកូនស្រីរបស់ខ្ញុំម្នាក់ឱ្យទៅអ្នក ហើយគាត់មានកូនស្រីច្រើន។ ២. ការយល់ព្រមទាំងពីរនាក់ប្តីប្រពន្ធ ដែលគ្រប់អាយុមានកាតព្វកិច្ច សាសនា និងដឹងក្តី។ ៣. អាណាព្យាបាល «الولي» ស្ត្រីមិនអាចរៀបការដោយខ្លួនឯងបានទេ ហើយមិនត្រូវរៀបការនាងឱ្យគេដោយគ្មានអាណាព្យាបាលដែរ។លើកលែងតែអាណាព្យាបាលហាមឃាត់នាងមិនឱ្យរៀបការជាមួយអ្នកដែលមានសមត្ថភាពសក្តិសមនឹងនាង។ អ្នកដែលមានសិទ្ធិរៀបការនាងគឺ ឪពុក បន្ទាប់មកជីតា បើរាប់ឡើងលើ បន្ទាប់មកកូនរបស់នាង និងចៅរបស់នាង បើរាប់ចុះក្រោម។ បន្ទាប់មកទៀត បងប្អូនប្រុសបង្កើត បន្ទាប់មកទៀតបងប្អូនប្រុសខាងឪពុក និងក្មួយប្រុស....។ ៤.សាក្សី ត្រូវតែជាបុរសចំនួនពីរនាក់ដែលគ្រប់អាយុ ដឹងក្តី និងស្មោះត្រង់ត្រឹមត្រូវ។ ៥.គូស្រករទាំងពីរនាក់គ្មានជាប់ពាក់ព័ន្ធនឹងប្រការដែលហាមឃាត់ដូចជាធ្លាប់បៅរួមគ្នាឬពូជអំបូរ ឬជន្លងនឹងគ្នា។ បំរាមរៀបការមាន **ទី១.ហាមរហូត** មានច្រើនផ្នែក **១. ពូជអំបូរ** មានម្តាយ ជីដូន បើរាប់ឡើងលើ។ កូនស្រី និងចៅស្រី បើរាប់ចុះក្រោម។ បងប្អូនស្រីបង្កើតដាច់ខាត ក្មួយបង្កើត និងចៅស្រី។ ចៅស្រីរបស់ពួកនាង បើរាប់ចុះក្រោម ។ ក្មួយស្រីបង្កើត ចៅស្រីបង្កើត និងរាប់ចុះក្រោម។ មីងខាងឪពុកនិងម្តាយ បើរាប់ឡើងលើ។ **២.ការបំបៅ** ការបៅទឹកដោះនេះគេហាមដូចពូជអំបូរដែរសូម្បីតែការធ្វើជន្លងនឹងគ្នា។ **៣. ជន្លង** ម្តាយក្មេក និងយាយប្រពន្ធ និងប្រពន្ធមា និងកូនស្រីប្រពន្ធចុង បើរាប់ចុះក្រោម។

**ទី២ ហាមបណ្តោះអាសន្ន** ស្ត្រីដែលគេហាមនេះមានពីរផ្នែក: ១.ដោយសារបងប្អូនស្រីបង្កើតទាំងពីរនាក់។ ២.ដោយសារឧបសគ្គ ហើយឧបសគ្គនេះអាចនឹងបាត់បង់ដូចជាប្រពន្ធអ្នកដទៃ។

**ហារ៉ាមលែងលះប្រពន្ធនៅពេលដែលនាងមានរដូវ មានឈាមឆ្លងទន្លេ ឬបន្ទាប់ពីជ្រះស្អាតតែបានរួមដំណេកជាមួយគ្នា។** ក៏ប៉ុន្តែការលែងលះនោះគឺដាច់។ មឹករ៉ូ




សលែងលះដោយគ្មានការចាំបាច់។ គេអនុញ្ញាតឱ្យលែងលះ បើសិនជាមានការចាំបាច់។ សូណាត់ចំពោះអ្នកដែលទទួលផលប៉ះពាល់ដោយសារការរៀបការ។ ការលែងលះមិនត្រូវស្តាប់តាមឪពុកម្តាយទេ។ នរណាចង់លែងលះប្រពន្ធគឺគេហាមអ្នកនោះលែងលះនាងលើសពីមួយដង ហើយត្រូវលែងលះនៅពេលនាងជ្រះស្អាត មិនទាន់រួមដំណេកជាមួយគ្នា។ គេលែងលះនាងតែម្តង ហើយត្រូវនៅបែកពីនាង។ មិនត្រូវបន្ថែមការលែងលះលើសពីនេះរហូតដល់នាងអស់អិតហ្វះ។ គេហាមចំពោះអ្នកដែលលែងលះរ៉ជអី(ត្រលប់មកជាគ្នាវិញ) មិនឱ្យនាងចាកចេញពីផ្ទះទេ ឬប្តីរបស់នាងឱ្យនាងចេញមុននឹងអស់អិតហ្វះ។ ការលែងលះកើតឡើងតាមរយៈពាក្យសម្តី មិនមែនកើតឡើងតាមរយៈការនៀតនោះទេ។

**អិតហ្វះមានច្រើនប្រភេទ:**

**១.ស្ត្រីមានផ្ទៃពោះ** អិតហ្វះនៃការលែងលះ ឬប្តីស្លាប់នោះផុតនៅពេលដែលនាងបង្កើតកូនរួច។ **២.ស្ត្រីប្តីស្លាប់ចោល:** អិតហ្វះរបស់នាង៤ខែ១០ថ្ងៃ ។

**៣.ស្ត្រីប្តីលែងខណៈនាងមានរដូវ:** អិតហ្វះរបស់នាងគឺបីដងនៃការមករដូវ ហើយអស់អ៊ិតហ្វះដោយជ្រះស្អាតពីរដូវលើកទីបី។

**៤.ស្ត្រីគ្មានរដូវ:** អិតហ្វះរបស់នាងចំនួនបីខែ។ អិតហ្វះស្ត្រីប្តីលែងដែលត្រលប់មកជាគ្នាវិញគឺនាងត្រូវនៅជាមួយប្តីរបស់នាងក្នុងពេលកំពុងកាន់អិតហ្វះ។ គេអនុញ្ញាតឱ្យប្តីនាងមើលនាងនូវអ្វីដែលគេចង់មើល។ មិនតែប៉ុណ្ណោះអាចនៅជាមួយនាងតែពីរនាក់រហូតដល់នាងអស់អិតហ្វះ សង្ឃឹមថាអល់ឡោះនឹងឱ្យអ្នកទាំងពីរជាគ្នាវិញ។ ការត្រលប់មកជាគ្នាវិញដោយគ្រាន់តែប្តីពោលពាក្យថា ខ្ញុំជាគ្នាជាមួយអ្នកវិញ ឬរួមដំណេកជាមួយគ្នា ហើយពុំចាំបាច់មានការយល់ព្រមពីប្រពន្ធនោះឡើយ។

**ការកាន់ទុក: គេហាមស្ត្រីកាន់ទុក្ខលើសពីបីថ្ងៃលើកលែងតែសពប្តីរបស់នាង។** នាងត្រូវកាន់ទុក្ខសពប្តីរបស់នាងចំនួន៤ខែ១០ថ្ងៃ។ ក្នុងពេលកាន់ទុក្ខនេះ នាងត្រូវបោះបង់ការតុបតែង និងប្រើប្រាស់គ្រឿងក្រអូបដូចជាល្មៀត ពាក់គ្រឿងអលង្ការ ចិញ្ចៀន និងសម្លៀកបំពាក់ពណ៌ស្រស់ឆើតដូចជាពណ៌ក្រហម និងពណ៌លឿង។ សម្អាងការដោយលាបក្រពេនឬផាត់ម្សៅ ឬលាបត្របកភ្នែកពណ៌ខ្មៅ ឬលាបប្រេងក្រអូប។ គេអនុញ្ញាតឱ្យនាងកាត់ក្រចក ដករោមក្លៀក និងមុជទឹកសម្អាត។ គេក៏មិនត្រូវកំណត់ឱ្យនាងពាក់សម្លៀកបំពាក់ណាមួយជាកំណត់ដែរដូចជាពណ៌ខ្មៅ។ នាងចាំបាច់ត្រូវកាន់អិតហ្វះក្នុងផ្ទះដែលប្តីរបស់នាងបានស្លាប់ ហើយគេហាមផ្លាស់ពីផ្ទះនោះ លើកលែងតែមានការចាំបាច់ ហើយនាងក៏មិនត្រូវចុះចេញពីផ្ទះលើកលែងតែមានការចាំបាច់នៅពេលថ្ងៃ។



**ការបំបៅដោះ: គេហាមចំពោះការបំបៅដោះនេះដូចការហាមចំពោះពូជអំបូរ ហើយមានលក្ខខណ្ឌបីយ៉ាង :**

**១.ទឹកដោះ**នោះមានដោយការឆ្លងទន្លេ មិនមែនតាមរយៈអ្វីផ្សេងនោះទេ។

២.ត្រូវបំបៅកូនរយៈពេលពីរឆ្នាំដំបូងបន្ទាប់ពីកូនកើតរួច។

៣.ការបំបៅនោះចាប់ពីប្រាំដងឡើងទៅ។ ការបៅដោះម្តងមានន័យថា ការបៅដោះរហូតដល់លែងបៅ មិនមែនមួយចម្អែតនោះទេ។ ការបំបៅដោះមិនមែនបញ្ជាក់ពីភាពស្របច្បាប់ក្នុងការទទួលប្រាក់ចំណាយ និងមរតកនោះទេ។

**ពាក្យសម្បថត្រូវផាកពិន័យដោយមានបួនលក្ខខណ្ឌ :**

**១.មានបំណងចង់ស្បថ** គេមិនចាត់ទុកជាសម្បថទេដោយគ្រាន់តែពោលនឹងអណ្ដាត តែគ្មានចេតនាស្បថ ហើយនេះគេហៅថាសម្បថលេងសើច ដូចជាគេថា «لَا وَاللهِ» «بَلَى وَاللهِ» នៅក្នុងការនិយាយស្តី។

**២.ស្បថទុកពេលអនាគតដែលអាចកើតឡើង:** មិនចាត់ទុកជាបានការចំពោះអតីតសម្បថដោយងងឹតល្ងង់ ឬស្មានថាខ្លួននិយាយពិត ឬកុហកដោយចេតនា (នេះគេហៅថាការស្បថភូតភរ ហើយជាអំពើបាបកម្រិតធ្ងន់) ឬស្បថសម្រាប់អនាគតដែលស្រពេចស្រពិលស្មានថាខ្លួននិយាយពិត តែក្រោយមកដឹងច្បាស់ថាកុហក។ **៣. ស្បថដោយស្ម័គ្រចិត្តគ្មានការបង្ខិតបង្ខំ ៤.ស្បថកុហក** ដូចជាគេធ្វើអ្វីដែលគេបានស្បថថាបោះបង់ ឬគេបោះបង់នូវអ្វីដែលគេបានស្បថថានឹងធ្វើ។ នរណាបានស្បថ ហើយភ្ជាប់ជាមួយពាក្យលើកលែងគឺមិនត្រូវផាកពិន័យទេដោយពីរលក្ខខណ្ឌ: ១.ស្បថដោយភ្ជាប់ជាមួយពាក្យលើកលែង។ ២.មានបំណងចង់ភ្ជាប់ពាក្យសម្បថជាមួយពាក្យលើកលែង ដូចជាពាក្យថា «وَاللهِ إِنْ شَاءَ اللهُ»។

អ្នកដែលស្បថធ្វើអ្វីមួយ ហើយឃើញផលប្រយោជន៍ផ្ទុយវិញ សូណាត់ត្រូវពិន័យលាសម្បថ ហើយធ្វើអ្វីដែលល្អ។

**ពិន័យលាសម្បថ:** ផ្តល់ចំណីអាហារឱ្យអ្នកក្រចំនួន១០នាក់។ ផ្តល់ឱ្យអ្នកក្រម្នាក់ៗទទួលបានកន្លះសាក(មួយគីឡូកន្លះ) ឬសម្លៀកបំពាក់ ឬដោះលែងទាសករម្នាក់។ ចំពោះអ្នកដែលគ្មានលទ្ធភាពត្រូវបួសបីថ្ងៃបន្តបន្ទាប់គ្នា។ ចំពោះអ្នកដែលបួសទាំងខ្លួនមានលទ្ធភាពផ្តល់ចំណីអាហារឬសម្លៀកបំពាក់ដល់អ្នកក្រគឺគេមិនទាន់រួចខ្លួនពីពាក្យសម្បថទេ។ គេអនុញ្ញាតឱ្យបង់ផាកពិន័យមុននិងក្រោយពេលស្បថកុហក។ ចំពោះអ្នកស្បថច្រើនដងលើរឿងតែមួយគឺត្រូវបង់ផាកពិន័យតែម្តងប៉ុណ្ណោះ។ តែបើស្បថលើរឿងច្រើនយ៉ាង ក៏ត្រូវបង់ផាកពិន័យច្រើនដងដែរ។

**សច្ចា: សច្ចាមានច្រើនប្រភេទដូចជា**





**១.សច្ចាទូទៅ** ដូចជាគេនិយាយថា (ខ្ញុំសូមសច្ចា បើខ្ញុំជាពីជំងឺ ខ្ញុំនឹងធ្វើជង្វាយជូនអល់ឡោះ ហើយគេនៅស្ងៀមមិនបាននៀតសច្ចាអ្វីមួយឱ្យច្បាស់សាល់ ដូច្នេះគេត្រូវបង់ផាកពិន័យលាសច្ចានៅពេលជាសះស្បើយ។
**២.សច្ចាដោយឡូឡាខឹងសម្បារ:** ការសច្ចាមានដាក់លក្ខខណ្ឌ ដោយនៀតហាមខ្លួនឯងធ្វើអ្វីមួយ ឬប្តេជ្ញាធ្វើអ្វីមួយដូចជាគេនិយាយថា (បើខ្ញុំនិយាយជាមួយអ្នក ខ្ញុំនឹងបួសចំនួនមួយឆ្នាំ) ច្បាប់តម្រូវឱ្យគេជ្រើសរើស រវាងការអនុវត្តតាមពាក្យសច្ចា និងបង់ផាកពិន័យលាសច្ចាឱ្យនៅពេលគេនិយាយ។
**៣.សច្ចាដែលគេអនុញ្ញាត:** ដូចជា (សូមស្បថនឹងអល់ឡោះ ខ្ញុំនឹងពាក់សម្លៀកបំពាក់របស់ខ្ញុំ)។ ច្បាប់តម្រូវឱ្យគេជ្រើសរើសរវាងពាក់សម្លៀកបំពាក់ ឬបង់ផាកពិន័យលាសច្ចា។ **៤.សច្ចាមឹករ៉ូស:** ដូចជា(សូមស្បថនឹងអល់ឡោះ ខ្ញុំនឹងលែងប្រពន្ធរបស់ខ្ញុំ) ច្បាប់តាមស៊ុណ្ណះតម្រូវឱ្យគេបង់ផាកពិន័យលាសច្ចា ហើយមិនត្រូវធ្វើតាមការសច្ចារបស់គេនោះទេ។ បើគេធ្វើក៏មិនត្រូវបង់ផាកពិន័យដែរ។
**៥.សច្ចាល្មើសច្បាប់:** ដូចជា(សូមស្បថនឹងអល់ឡោះខ្ញុំនឹងលួច) ច្បាប់ហាមធ្វើតាមពាក្យសច្ចានេះ ហើយគេត្រូវបង់ផាកពិន័យលាសច្ចាផងដែរ។ តែប្រសិនបើគេធ្វើគឺគេនឹងមានទោសពៃហ៍ ហើយគេមិនត្រូវបង់ផាកពិន័យលាសច្ចានោះទេ។
**៦.សច្ចាប្រណិប័តន៍:** ដូចជា (សូមស្បថនឹងអល់ឡោះខ្ញុំនឹងសឡាតនេះ) ក្នុងគោលបំណងបញ្ជិតខ្លួនចំពោះអល់ឡោះ។ បើសិនជាគេដាក់លក្ខខណ្ឌដូចជាជាសះស្បើយពីជំងឺគឺគេត្រូវអនុវត្ត បើសិនជាគេទទួលបានដូចបំណង។ តែបើសិនជាអត់មានលក្ខខណ្ឌទេគឺអនុវត្តតាមពាក្យសច្ចានោះពេលណាក៏បានដែរ។
**បណ្តាំក្រោយពេលស្លាប់:** បណ្តាំនេះជាកាតព្វកិច្ចចំពោះអ្នកដែលមានភារកិច្ចដោយគ្មានការបញ្ជាក់ជាលាយលក្ខណ៍អក្សរ។ ដូច្នេះគេផ្តែផ្តាំឱ្យចំពោះអ្នកដែលមានភារកិច្ចបំពេញតាមការបណ្តាំរបស់គេ។ សូណាត់ចំពោះអ្នកដែលមានទ្រព្យសម្បត្តិច្រើន គប្បីផ្តែផ្តាំឱ្យគេបរិច្ចាគមួយភាគប្រាំនៃទ្រព្យសម្បត្តិរបស់គេឱ្យអ្នកក្រដែលជាប់សាច់ញាតិដែលគ្មានសិទ្ធិទទួលមរតក បើគ្មានសាច់ញាតិទេត្រូវឱ្យអ្នកក្រ អ៊ូឡាម៉ាកអ្នកចេះដឹង និងអ្នកដែលមានកុសលធម៌។ មឹករ៉ូសធ្វើបណ្តាំចំពោះអ្នកក្រដែលគាត់មានអ្នកទទួលមរតក។ លើកលែងតែពួកគេជាអ្នកមាន ទើបគេអនុញ្ញាត។ ហើយគេហាមលើសពីមួយភាគបីសម្រាប់ឱ្យអ្នកដទៃ។ គេហាមបណ្តាំឱ្យផ្តល់ទ្រព្យ មរតកសម្រាប់អ្នកដែលមានសិទ្ធិទទួលមរតកសូម្បីបន្តិចបន្តួច។ លើកលែងតែអ្នកមានសិទ្ធិទទួលទ្រព្យមរតកអនុញ្ញាតបន្ទាប់ពីសពស្លាប់។ បណ្តាំត្រូវទុកជាមោឃៈដោយគ្រាន់តែអ្នកបណ្តាំនោះនិយាយថា ខ្ញុំលែងបណ្តាំ ឬខ្ញុំលុប



ចោលការបណ្តាំ ឬខ្ញុំផ្លាស់ប្តូរវិញ។ល។

**គប្បីសរសេរបណ្តាំមរតកចាប់ផ្តើមដោយ :**

«بِسْمِ اللهِ الرَّحْمَنِ الرَّحِيمِ هَذا مَا أَوْصَى بِهِ فُلانٌ أَنَّهُ يَشْهَدُ أَنْ لا إِلَهَ إلا اللَّهَ وَحْدَهُ لا شَرِيكَ لَهُ، وَأَنَّ مُحَمَّدًا عَبْدُهُ وَرَسُولُهُ، وَأَنَّ الْجَنَّةَ حَقٌّ، وَأَنَّ النَّارَ حَقٌّ، وَأَنَّ السَّاعَةَ آتِيَةٌ لا رَيْبَ فِيهَا، وَأَنَّ اللَّهَ يَبْعَثُ مَنْ فِي الْقُبُورِ. وَأُوصِي مَنْ تَرَكْتُ مِنْ أَهْلِي أَنْ يَتَّقُوا اللَّهَ وَيُصْلِحُوا ذات بَيْنِهِمْ، وَيُطِيعُوا اللهَ وَرَسُولَهُ إِنْ كَانُوا مُؤْمِنِينَ. وَأُوصِيهِمْ بِمَا أَوْصَى بِهِ إِبْرَاهِيمُ بَنِيهِ وَيَعْقُوبُ: ﴿ يَا بَنِيَّ إِنَّ اللَّهَ اصْطَفَى لَكُمُ الدِّينَ فَلَا تَمُوتُنَّ إِلَّا وَأَنتُم مُّسْلِمُونَ ﴾ البقرة: ١٣٢

សូណាត់នៅពេលសឡាវ៉ាតទៅចំពោះណាពីត្រូវសំយោគចូលគ្នារវាងសឡាវ៉ាត និងសាឡាម «الصلاة» និង «التسليم» មិនត្រូវពោលត្រឹមតែពាក្យសឡាវ៉ាតមួយម៉ាត់ ឬសាឡាមនោះទេ។ ចំពោះអ្នកដទៃផ្សេងពីពួកណាពី មិនត្រូវសឡាវ៉ាតចំពោះពួកគាត់ដោយផ្តើមចេញពីឈ្មោះរបស់ពួកគាត់តែឯងនោះទេ គេមិនត្រូវនិយាយថា (أبوبكر) (أبوبكر ﷺ) ធ្វើដូច្នេះគឺជាប្រការមើករ៉ូសកម្រិតស្រាល។ គេអនុញ្ញាតពោលពាក្យនេះ បើសិនជាអ្នកផ្សេងក្រៅពីណាពីនោះគឺហៅភ្ជាប់បន្ទាប់ពីឈ្មោះណាពីថា (اللَّهُمَّ صَلِّ عَلَى مُحَمَّدٍ وعَلَى آلِ محمدٍّ وَأَصْحَابِهِ وأَزْوَاجِهِ وذُرِّيَّتِهِ) សូណាត់ឱ្យពោលពាក្យថា (رَضِيَ اللهُ عَنْهُ) និង (رَحِمَهُمُ اللهُ) សម្រាប់ពួកសហាហ្ពាត់ និងពួកតាពិអ៊ីន ព្រមទាំងពួកអ្នកជំនាន់ក្រោយពួកគាត់នៃពួកអ៊ូឡាម៉ាក ពួកអ្នកមានចំណេះដឹង ពួកអុបហ្គាត (ពួកអ្នកប្រតិបត្តិចំពោះអល់ឡោះ) និងពួកកុលសបុគ្គលទាំងឡាយ។ ដូចជាឈ្មោះ អាពូហានីហ្វះ ម៉ាលិក ស្យាហ្វីអ៊ីយ៍ និងអះម៉ាត់ យើងត្រូវពោលពាក្យ (رَضِيَ اللهُ عَنْهُمْ) ឬ (رَحِمَهُمُ اللهُ)។

**អ្នកដែលទទួលរងគ្រោះថ្នាក់** ហើយចង់សម្រាលទម្ងន់គ្រោះថ្នាក់នោះ និងធ្វើឱ្យមានភាពធូរស្រាល គឺគេត្រូវគិតថា នៅមានគ្រោះថ្នាក់ដែលធំជាងនោះ ហើយត្រូវគិតរំពឹងដល់ផលបុណ្យនៃគ្រោះថ្នាក់នោះ។

ត្រូវនឹកស្រមៃថានៅមានគ្រោះថ្នាក់ដែលធ្ងន់ធ្ងរជាងនោះទៀត។

**ការសម្លេះសត្វ:**

ចាំបាច់ក្នុងការសម្លេះសត្វដើម្បីឱ្យយើងអាចបរិភោគសាច់របស់វា ហើយលក្ខខណ្ឌនៃសត្វទាំងនោះមានដូចជា៖ ១/ជាសត្វដែលគេអនុញ្ញាតឱ្យបរិភោគវា ២/ ជាសត្វដែលអាចប្រមាញ់ចាប់វាបាន ៣/ ជាសត្វដែលរស់នៅលើគោក។

**ការសម្លេះដែលហូបសាច់បានចាំបាច់ត្រូវមានបួនលក្ខខណ្ឌ :**

១.អ្នកសម្លេះជាមនុស្សមានបញ្ញា ២.ឧបករណ៍សម្លេះពុំមែនជាធ្មេញ ឬក្រចក ពីព្រោះគេមិនអនុញ្ញាតឱ្យសម្លេះនឹងរបស់ទាំងពីរនេះទេ។





៣.អារបំពង់ក និងបំពង់អាហារ (បំពង់អាហារផ្នែកខាងលើ) និងសរសៃបំពង់ក ឬអាចអារសសៃណាមួយក៏បានក្នុងចំណោមសសៃទាំងពីរនេះ។
៤.សូត្រពិសមិលឡះនៅពេលធ្វើសកម្មភាពសម្លេះ គេអនុញ្ញាតឱ្យសូត្រក្រៅពីភាសាអារ៉ាប់។ សូណាត់សូត្រពិសមិលឡះជាមួយនឹងតឹកពៀរ។ តែបើសិនជាភ្លេចគឺមិនមានបញ្ហាអ្វីទេ ខ្លាចតែមិនចេះគឺគេមិនអនុញ្ញាតឡើយ។

**ការបរបាញ់សត្វ:**

**គឺការបរបាញ់សត្វព្រៃទូទៅដែលហាឡាល់ តាមធម្មតាគេមិនអាចគ្រប់គ្រងវាបាន:** ច្បាប់អនុញ្ញាតសម្រាប់អ្នកដែលមានបំណងចង់បរបាញ់។ តែមឹករ៉ូសចំពោះការបរបាញ់លេងកម្សាន្ត។ បើសិនជាការបរបាញ់នោះបង្កផលប៉ះពាល់ដល់ផលដំណាំ និងផ្ទះសម្បែងរបស់មនុស្សគឺគេហាមបរបាញ់។ លក្ខខណ្ឌដែលគេអនុញ្ញាតឱ្យបរបាញ់សត្វមានបួន:
១. អ្នកបរបាញ់សត្វជាអ្នកដែលការសម្លេះរបស់គាត់អាចហូបបាន។
២.ឧបករណ៍ដែលបរបាញ់នោះ ជាឧបករណ៍ដែលគេអនុញ្ញាតឱ្យប្រើប្រាស់សម្រាប់សម្លេះសត្វបាន ត្រូវតែមុតស្រួច ដូចជាលំពែង គ្រាប់ព្រួញ។ល។ បើសិនជាការបរបាញ់នោះដោយប្រើសត្វសាហាវដូចជាសត្វឥន្ទ្រី ឬសត្វសុនខ(ឆ្កែ) ចាំបាច់ត្រូវតែជាសត្វដែលគេបង្ហាត់ឱ្យវាចេះបរបាញ់យ៉ាងស្ទាត់ជំនាញ។
៣. មានបំណងចង់បរបាញ់គឺបញ្ជូនសត្វនោះទៅក្នុងគោលបំណងបរបាញ់។ តែបើសិនជាវាបរបាញ់ដោយម្ចាស់របស់វាពុំបានតាំងចិត្តគឺមិនហាឡាល់បរិភោគសាច់សត្វនោះទេ។ ៤.សូត្រពិសមិលឡះនៅពេលបញ្ជូនឧបករណ៍ទាំងនោះ បើសិនជាគេភ្លេចសូត្រគឺគេមិនលើកលែងនោះទេ។ ហារ៉ាមបរិភោគសត្វដែលបរបាញ់ដោយពុំបានសូត្រពិសមិលឡះ។

**ចំណីអាហារ: គឺគ្រប់របស់ដែលគេអាចទទួលទាន និងផឹកបាន ជាមូលដ្ឋានរបស់អ្វីគ្រប់យ៉ាងគឺហាឡាល់។ ចំណីអាហារដែលហាឡាល់ត្រូវមានបីលក្ខខណ្ឌ:**
១.ចំណីអាហារនោះត្រូវតែស្អាត
២. ចំណីអាហារនោះ ចាំបាច់ត្រូវតែគ្មានផលប៉ះពាល់ ឬគ្រោះថ្នាក់។
៣.មិនប្រឡាក់របស់កខ្វក់។ គេហាមបរិភោគរាល់ចំណីអាហារដែលកខ្វក់ដូចជាឈាម និងសាកសព។ របស់ដែលមានផលប៉ះពាល់ដូចជាថ្នាំពុល។ របស់ប្រឡាក់ភាពកខ្វក់ដូចជាលាមក ទឹកនោម ចៃ និងសត្វល្អិត។

**សត្វលើគោកដែលគេហាម:** សត្វលាស្រុក និងសត្វសាហាវ ដែលមានចង្កូមដូចជាសត្វតោ ខ្លា ឆ្កែចចក ខ្លាឃិន ឆ្កែ ជ្រូក ស្វា និងឆ្មា កញ្ជ្រោង និងកំប្រុកលើកលែង



តែចចកស្វានប៉ុណ្ណោះ។ គេហាមបរិភោគសត្វដែលប្រមាញ់ដោយប្រើប្រាស់ក្រញ៉ាំ ដូចជាសត្វឥន្ទ្រី ស្ទាំង ខ្លែង និងសត្វទីទុយ។ សត្វដែលស៊ីសាកសពដូចជាសត្វត្មាត និងសត្វដទៃទៀតដែលអារ៉ាប់នៅតំបន់ផ្សេងៗបានចាត់ទុកថាជាសត្វអាក្រក់ ដូចជាសត្វកណ្តុរ សត្វឱម៉ាល់ ឃ្មុំ រុយ មេអំបៅ ត្រសេះ កាំប្រមា សត្វល្មូន និងសត្វពស់។ សត្វល្អិតដូចជា ដង្កូវ ខ្ទួត អណ្តើកមាស កញ្ចែរ និងជីងចក់។ សត្វដែលច្បាប់ឥស្លាមបានប្រើឱ្យសម្លាប់ដូចជាសត្វក្អែប ឬហាមសម្លាប់ដូចជាសត្វស្រមោច។ កូនសត្វកាត់ជាមួយនឹងសត្វគេហូបសាច់ និងសត្វគេហាមហូបសាច់ដូចជាសីម៉ាក់គឺកាត់ចចកស្វាន និងឆ្កែចចក។ មិនហាមចំពោះកូនសត្វដែលកាត់ជាមួយនឹងសត្វហាឡាល់ពីរក្បាលផ្សេងគ្នាដូចជាសេះទេសដែលកាត់រវាងសត្វលា និងសេះ។ នៅមានសត្វដទៃច្រើនទៀតដែលអារ៉ាប់មិនបានដឹង ហើយច្បាប់ឥស្លាមក៏អត់បានរៀបរាប់ប្រាប់ដែរ។ ចម្លើយគឺស្របនឹងការប្រៀបធៀបរបស់ពួកហ៊ីដើស បើសិនជាវាដូចនឹងសត្វហារ៉ាមគឺហារ៉ាម ឬបើសិនជាដូចសត្វហាឡាល់គឺហាឡាល់។ បើសិនជារបស់ហាឡាល់នោះស្រដៀងនឹងរបស់ហារ៉ាមជាងគឺចាត់ទុកថាហារ៉ាម។ ក្រៅពីនោះជាសត្វដែលគេអនុញ្ញាត ដូចជាសត្វពាហនៈ សត្វសេះ និងសត្វផ្សេងទៀតដូចជាសត្វករវែង សត្វទន្សាយ និងសត្វដែលស៊ីស្លឹកឈើជាអាហារ និងសត្វរមាំង ប្រើស។ ប្រភេទសត្វស្លាបដូចជា អូទ្រីស មាន់ ក្ងោក សេក ព្រាប សត្វស្លាបតូចៗ ទា ក្ងាន និងសត្វដែលរស់នៅក្នុងទឹកទាំងអស់លើកលែងតែកង្កែប ពស់ និងក្រពើ។ ចំណែកឯដំណាំ និងផ្លែឈើដែលគេស្រោច ដាក់ជីពីរបស់កខ្វក់ គេអនុញ្ញាតឱ្យបរិភោគលើកលែងតែមានរសជាតិរបស់កខ្វក់នោះ និងក្លិនអាក្រក់របស់វាគឺហារ៉ាម។ មឹករ៉ូសស៊ីធ្យូង ធូលី និងដី ខ្ទឹមបារាំង និងខ្ទឹមសរ។ល។ លើកលែងតែក្រោយពីចម្អិនរួច តែបើសិនជាឃ្លានខ្លាំងហើយ ចាំបាច់ត្រូវតែបរិភោគដើម្បីបំបាត់ការស្រេកឃ្លានតែប៉ុណ្ណោះ។

**គេហាមអបអរសាទរពួកកាហ្វៀរ** ឬចូលរួមក្នុងពិធីបុណ្យរបស់ពួកគេ ឬឱ្យសាឡាមពួកគេមុន។ បើសិនជាពួកគេឱ្យសាឡាមមុន ចាំបាច់ត្រូវឆ្លើយតបទៅពួកគេវិញថា វ៉ាអាឡៃកុម។ គេហាមឈរគោរពពួកគេ និងពួកអ្នកដែលប្រព្រឹត្តអំពើពិតអះ។ មឹករ៉ូសចាប់ដៃជាមួយនឹងពួកគេ។ រីឯការរំលែកទុក្ខ និងការទៅសួរសុខទុក្ខពេលគេឈឺគឺហារ៉ាម លើកលែងតែធ្វើក្នុងបុព្វហេតុដើម្បីការពារផលប្រយោជន៍ដែលស្របនឹងច្បាប់សាសនាតែប៉ុណ្ណោះ។




# របៀនដែលស្របច្បាប់ស្សារីអាត់

ពិតណាស់ អ្នកដែលពិចារណាចំពោះច្បាប់ក្រឹត្យក្រមរបស់អល់ឡោះច្បាស់ជាដឹងថា គ្រោះថ្នាក់ទាំងអស់គឺជាក្រឹត្យក្រមមួយនៃក្រឹត្យក្រមចក្រវាលទាំងមូលដែលទ្រង់បានកំណត់។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :

﴿وَلَنَبۡلُوَنَّكُم بِشَيۡءٖ مِّنَ ٱلۡخَوۡفِ وَٱلۡجُوعِ وَنَقۡصٖ مِّنَ ٱلۡأَمۡوَٰلِ وَٱلۡأَنفُسِ وَٱلثَّمَرَٰتِۗ وَبَشِّرِ ٱلصَّٰبِرِينَ﴾មានន័យថា: «យើងច្បាស់ជានឹងសាកល្បងពួកអ្នកដោយការភ័យខ្លាច និងគ្រោះទុរភិក្សនិងខ្វះខាតទ្រព្យសម្បត្តិ ស្លាប់បាត់បង់ជីវិត និងខាតបង់ផលដំណាំ។ ចូរអ្នក( ណាពីមូហាំម៉ាត់) ផ្តល់ដំណឹងរីករាយដល់ពួកអ្នកដែលអត់ធ្មត់»។(អាល់បាក់ហ្គោរ៉ោះ : ១៥៥)

ជាកំហុសឆ្គងចំពោះអ្នកដែលគិតស្មានថា បុគ្គលប្រតិបត្តិនូវកុសលធម៌មិនបានទទួលរងគ្រោះថ្នាក់។ តាមពិតគ្រោះថ្នាក់ជា ភស្តុតាងបញ្ជាក់ពីជំនឿ។ គេបានសួរណាពី( )ថា មានន័យថា: «ពិតណាស់ គេបានសួរណាពីថា តើមនុស្សណាដែលទទួលរងគ្រោះថ្នាក់ ឬការសាកល្បងខ្លាំងជាងគេ? គាត់បានឆ្លើយថា : «ពួកណាពី បន្ទាប់មក ពួកអ្នកប្រតិបត្តិកុសលធម៌ បន្ទាប់មកទៀតពួកអ្នកដែលល្អប្រសើរជាងគេជាបន្ត បន្ទាប់នៃមនុស្សទាំងឡាយ។ គាត់បានមានប្រសាសន៍ថា: គេសាកល្បងមនុស្សអាស្រ័យតាមជំនឿរបស់គេ បើសិនជាជំនឿរបស់អ្នកនោះរឹងមាំហើយ គេបន្ថែមការសាកល្បងលើអ្នកនោះបន្ថែមទៀត។ បើសិនជាជំនឿរបស់អ្នកនោះនៅទន់ខ្សោយ គឺគេសម្រាលការសាកល្បង»។ (អ៊ីបនូម៉ាយ៉ះ)

ការសាកល្បងជាសញ្ញាមួយនៃសញ្ញាៗដែលបញ្ជាក់ពីការស្រលាញ់សព្វព្រះទ័យរបស់អល់ឡោះចំពោះខ្ញុំបម្រើរបស់ទ្រង់។ ណាពីម៉ូហាំម៉ាត់បានមានប្រសាសន៍ថា: មានន័យថា: «ពិតណាស់ បើសិនជាអល់ឡោះស្រលាញ់សព្វព្រះទ័យក្រុមណាមួយ គឺទ្រង់សាកល្បងពួកគេ»។ (អះម៉ាត់ )

នេះជាសញ្ញាបញ្ជាក់ពីសេចក្តីប្រាថ្នារបស់អល់ឡោះចង់ឱ្យខ្ញុំបម្រើរបស់ទ្រង់ទទួលសេចក្តីល្អ។ ណាពីម៉ូហាំម៉ាត់បានមានប្រសាសន៍ថា: មានន័យថា: «បើសិនជាអល់ឡោះប្រាថ្នាចង់ឱ្យខ្ញុំបម្រើរបស់ទ្រង់ទទួលបានសេចក្តីល្អគឺទ្រង់ប្រញាប់ដាក់ទណ្ឌកម្មលើគេភ្លាមៗនៅក្នុងលោកីយ៍នេះ។ ម្យ៉ាងទៀត បើសិនជាអល់ឡោះប្រាថ្នាចង់ឱ្យខ្ញុំបម្រើរបស់ទ្រង់ទទួលសេចក្តីអាក្រក់នោះគឺទ្រង់មិនដាក់ទណ្ឌកម្មលើគេដោយសារកំហុសរបស់គេទេ រហូតដល់ទ្រង់នឹងតបស្នងឱ្យគេវិញនៅថ្ងៃបរលោក»។(អាត់តៀរមីហ្ស៊ី)

ទណ្ឌកម្មនេះគឺជាការលុបលាងអំពើបាប ទោះបីទណ្ឌកម្មនោះតិចតួចក៏ដោយ។ ណាពីម៉ូហាំម៉ាត់ បានមានប្រសាសន៍ថា: មានន័យថា: «គ្មានអ្នកមូស្លីមណាម្នាក់




ទទួលរងគ្រោះដោយសារបន្លារមុត និងអ្វីដែលតិចតួចជាងនោះ លើកលែងតែអល់ឡោះលុបលាងអំពើបាបទាំងឡាយរបស់គេ ប្រៀបបីដូចជាស្លឹកឈើជ្រុះពីដើមដែរ»។ (អាល់ពូខរី និងមូស្លីម) ដូច្នេះ បើសិនជាអ្នកមូស្លីមដែលរងការសាកល្បងនោះជាមនុស្សប្រតិបត្តិកុសលធម៌គឺការល្បងនោះលាងជម្រះសម្អាតអំពើបាបដែលកន្លងផុត ឬលើកឋានៈឋានសួគ៌មួយកម្រិត។ បើសិនជាអ្នកនោះជាអ្នកដែលប្រព្រឹត្តអំពើបាបគឺជាការជម្រះសម្អាតអំពើបាប និងដាស់តឿនរំឭកគេពីផលគ្រោះថ្នាក់នៃអំពើអាក្រក់។ **អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា :** ﴿ ظَهَرَ ٱلْفَسَادُ فِى ٱلْبَرِّ وَٱلْبَحْرِ بِمَا كَسَبَتْ أَيْدِى ٱلنَّاسِ لِيُذِيقَهُم بَعْضَ ٱلَّذِى عَمِلُوا۟ لَعَلَّهُمْ يَرْجِعُونَ ﴾ មានន័យថា: «គ្រោះមហន្តរាយបានកើតឡើងនៅលើគោក និងនៅក្នុងសមុទ្រដោយសារស្នាដៃរបស់មនុស្សលោកបានប្រព្រឹត្ត ដើម្បីទ្រង់ធ្វើឱ្យពួកគេភ្លក្សរសជាតិនូវទង្វើខ្លះដែលពួកគេបានប្រព្រឹត្ត។សង្ឃឹមថាពួកគេ និងវិលត្រឡប់(កែខ្លួន)»។(អារ៉ូម : ៤១)

ការសាកល្បងមានច្រើនប្រភេទ: ទី១សាកល្បងដោយគ្រោះល្អ ដូចជាមានទ្រព្យសម្បត្តិស្តុកស្តម្ភ។ ទី២ការសាកល្បងដោយគ្រោះអាក្រក់ ដូចជាការភ័យខ្លាចគ្រោះទុរភិក្ស និងការខាតបង់ទ្រព្យសម្បត្តិ។ អល់ឡោះជាម្ចាស់ទ្រង់បានមានព្រះបន្ទូលថា: ﴿ وَنَبْلُوكُم بِٱلشَّرِّ وَٱلْخَيْرِ فِتْنَةً ﴾ មានន័យថា: «យើងនឹងសាកល្បងពួកអ្នកដោយគ្រោះអាក្រក់ និងគ្រោះល្អ»។ (អាល់អាំពីយ៉ាអ : ៣៥)

ការសាកល្បងខ្លះដោយជំងឺឈឺថ្កាត់ ស្លាប់បាត់បង់ជីវិត ហើយមូលហេតុចម្បងបំផុតនៃជំងឺ និងសេចក្តីស្លាប់គឺក្តៅភ្នែក និងអំពើអាបធ្មប់កើតឡើងដោយសារការឈ្នានីស។ ណាពី( )បានមានប្រសាសន៍ថា: មានន័យថា: «ប្រជាជាតិរបស់ខ្ញុំស្លាប់ភាគច្រើនបន្ទាប់ពីការកំណត់របស់អល់ឡោះ (القضاء والقدر) គឺដោយសារជំងឺក្តៅភ្នែក(ការឈ្នានីសក្តៅក្រហាយ)»។(អាតតយ៉ាលីស៊ី)

ការបង្ការទុកជាមុន: យើងគប្បីយល់ដឹងពីវិធីបង្ការជំងឺក្តៅភ្នែក និងជំងឺអាបធ្មប់មុននឹងវាកើតឡើង និងអនុវត្តតាមវិធីនេះ ហើយការពារប្រសើរជាងព្យាបាល។

**វិធីបង្ការមានដូចជា :** ពង្រឹងស្មារតីដោយគោលជំនឿ។

ជឿថាអ្នកដែលចាត់ចែងកិច្ចការចក្រវាលទាំងមូលគឺអល់ឡោះជាម្ចាស់ និងបង្កើនការធ្វើអំពើល្អ។

❖ សង្ឃាល្អចំពោះអល់ឡោះ និងពឹងផ្អែកចំពោះទ្រង់ មិនត្រូវមានចិត្តសង្ស័យចំពោះជំងឺ និងអំពើអាបធ្មប់នៅពេលប្រឈមមុខនឹងឧបសគ្គ ហើយការសង្ស័យ

នោះឯងវាជាជំងឺ[1]។

❖ បើសិនជាល្បីថា បុគ្គលណាម្នាក់ពូកែភ្នែកឈ្នានីសគេ ឬជាគ្រូមន្តអាគមគឺគេត្រូវជៀសឆ្ងាយពីបុគ្គលនោះក្នុងន័យយកហេតុជាបច្ច័យ មិនមែនខ្លាចនោះទេ។

❖ នៅពេលឃើញអ្វីមួយគួរឱ្យចាប់ចិត្តចាប់អារម្មណ៍គឺត្រូវហ្ស៊ីកៀរចំពោះអល់ឡោះ និងសូត្រ «بَارِكْ اللهُ لَك» ។ ណាពីម៉ូហាំម៉ាត់បានមានប្រសាសន៍ថា : មានន័យថា: «**នៅពេលនរណាម្នាក់ក្នុងចំណោមអ្នក ចាប់អារម្មណ៍ស្រលាញ់ចំពោះខ្លួនឯង ឬទ្រព្យសម្បត្តិរបស់ខ្លួន ឬបងប្អូនរបស់គេ ចូរអ្នកនោះសូត្រថា :** « بَارَكَ اللهُ لَكَ» **ពីព្រោះភ្នែក(ឥទ្ធិពលរបស់វា)គឺការពិត**»។(អាល់ហាគីម) យើងត្រូវពោលពាក្យថា «بَارَكَ اللهُ لَكَ » មិនមែនពាក្យថា «تَبَارَكَ اللهُ » ទេ។

❖ វិធីព្យាបាល និងបង្ការជំងឺអាបធ្មប់គឺព្រឹកឡើងត្រូវហូបផ្លែល្មើ(ដំណាប់ល្មើ) ដែលយកមកពីម៉ាឌីណះចំនួនប្រាំពីរគ្រាប់ជារៀងរាល់ព្រឹក។

❖ សុំជ្រកកោនជាមួយនឹងអល់ឡោះ ពឹងពាក់ចំពោះទ្រង់ និងសង្ឃឹមល្អចំពោះទ្រង់ សុំឱ្យទ្រង់បញ្ចៀសពីការភ្នែកដែលឈ្នានីស និងជំងឺអាបធ្មប់។ ត្រូវរក្សាការហ្ស៊ីកៀរពេលព្រឹក និងពេលល្ងាចជារៀងរាល់ថ្ងៃ[2]។ ហ្ស៊ីកៀរមានឥទ្ធិពលខ្លាំង ឬខ្សោយអាស្រ័យលើព្រះទ័យអនុញ្ញាតរបស់អល់ឡោះ ដោយពីរប្រការ :

១. ត្រូវមានជំនឿថាអ្វីដែលមាននៅក្នុងហ្ស៊ីកៀរ គឺពិតប្រាកដ និងត្រឹមត្រូវ ហើយវាមានប្រយោជន៍ដោយការអនុញ្ញាតពីអល់ឡោះជាម្ចាស់។

២. ពោលដោយអណ្ដាត ផ្ទៀងស្ដាប់ដោយត្រចៀក និងតាំងចិត្តមោះមុត។ ពីព្រោះវាជាទូអា ហើយគេមិនទទួលយកទូអាពីចិត្តដែលរសាត់អណ្ដែតនោះទេ ដូចមានរីវ៉ាយ៉ាត់សហេសអំពីណាពី។

**ពេលវេលាហ្ស៊ីកៀរ:** ហ្ស៊ីកៀរពេលព្រឹកគេសូត្របន្ទាប់ពីសឡាតសូហ្ពោះរួច ឯចំណែកហ្ស៊ីកៀរពេលល្ងាចគឺសូត្របន្ទាប់ពីសឡាតអាសើររួច។ តែបើសិនជាអ្នកមូស្លីមភ្លេចមិនសូត្រ គេគប្បីសូត្រនៅពេលគេនឹកឃើញឡើងវិញ។

**សញ្ញាបញ្ជាក់ពីការដែលត្រូវអំពើគេ និងជំងឺផ្សេងទៀត:**

វិជ្ជាពេទ្យ និងរបៀនដែលស្របនឹងច្បាប់ស្ស៊ារីអាត់មិនផ្ទុយគ្នានោះទេ។ គម្ពីរអាល់គួរអានជាថ្នាំព្យាបាលជំងឺសរីរាង្គ និងជំងឺផ្លូវចិត្ត។ តែបើសិនជាអ្នកនោះគ្មានជំងឺស

---

[1] វេជ្ជបណ្ឌិត និងពួកអ្នកវិទ្យាសាស្ត្របាននិយាយថា ជំងឺសន្លាក់ភាគច្រើនកើតឡើងដោយសង្ស័យថាមានជំងឺ តែតាមពិតវាមិនមានជំងឺអ្វីនោះទេ។

2 ចូរមើលហ្ស៊ីកៀរពេលព្រឹកនិងពេលល្ងាចនៅទំព័រ



វិវាង្គទេ រោគសញ្ញានៃការដែលត្រូវអំពើគេគឺឈឺក្បាលគ្រប់កន្លែង ម្ដងឈឺកន្លែងនេះ ម្ដងឈឺកន្លែងនោះ មុខឡើងលឿងស្លេកស្លាំង បែកញើសច្រើន និងនោមញឹកមិនសូវឃ្លានចំណី ព្រឹរោម ឬក្ដៅ និងត្រជាក់ចុងដៃចុងជើង ញ័រដើមទ្រូវ ឈឺរោយខ្នង រសាប់រសល់ និងរោយចុកស្មាទាំងពីរ កង្វល់ច្រើន និងថប់ក្នុងទ្រូង អត់ងងុយនៅពេលយប់ រន្ធត់ខ្លាំងដោយការភ័យខ្លាច និងខឹងច្រឡោតខុសពីប្រក្រតី ភើនិងដកដង្ហើមខ្លាំង ចូលចិត្តនៅម្នាក់ឯង ស្ពឹកស្រពន់ ខ្ជិលច្រអូស ចូលចិត្តដេកទ្រមក់ បញ្ហាសុខភាពផ្សេងទៀតដែលអត់មានហេតុផលផ្នែកវេជ្ជសាស្ត្រ។ ជួនកាលលេចឡើងនូវសញ្ញាទាំងអស់នេះ ឬមួយចំនួនតាមកម្លាំងខ្លាំងខ្សោយរបស់អ្នកជំងឺ។ អ្នកមូស្លីមត្រូវតែមានជំនឿរឹងមាំ និងស្មារតីរឹងប៉ឹង កុំឱ្យភាពរំខានញាំញីអ្នក មិនត្រូវគិតថាខ្លួនឯងឈឺដោយគ្រាន់តែមានអារម្មណ៍ថាខ្លួនឯងត្រូវអំពើគេ។ ពីព្រោះភាពសង្ស័យជាជំងឺដែលពិបាកព្យាបាលជាទីបំផុត។ រោគសញ្ញាទាំងនេះក៏អាចកើតមានចំពោះ ពួកអ្នកដែលមានសុខភាពល្អផងដែរ ជួនកាលអាចបណ្ដាលមកពីជំងឺសរីរាង្គ ជួនកាលបណ្ដាលមកពីខ្សោយជំនឿ ដូចជាថប់ក្នុងទ្រូង ព្រួយភ័យខ្ជិលទ្រមក់ បើមានរោគសញ្ញាបែបនេះចាំបាច់ឱ្យអ្នកនោះពិនិត្យសាឡើងវិញនូវទំនាក់ទំនងរបស់គេជាមួយនឹងអល់ឡោះជាម្ចាស់។

**បើសិនជាជំងឺនោះបណ្ដាលមកពីការក្ដៅភ្នែក[1] វិធីព្យាបាលមានពីរយ៉ាង :**

**១. បើសិនជាគេស្គាល់អ្នកក្ដៅភ្នែក:** ត្រូវឱ្យគេទៅមុជទឹក ហើយយកទឹកនេះ ឬយកទឹកដែលនៅសល់របស់អ្នកនោះមកឱ្យអ្នកជម្ងឺមុជ។

**២\ បើសិនជាគេមិនស្គាល់អ្នកក្ដៅភ្នែកនោះ:** គេត្រូវព្យាបាលដោយរុកយ៉ះ (របៀន) ទូអានិងជប់ឈាម។

**តែបើសិនជាជំងឺនោះដោយអំពើមន្តអាគមវិញ[2] វិធីព្យាបាលមានពីរយ៉ាង :**

---

[1] العين ជាគ្រោះថ្នាក់បណ្ដាលមកពីជិនដែលអល់ឡោះអនុញ្ញាតឱ្យកើតមាននៅត្រង់ភ្នែកដោយសារការរៀបរាប់ និងចាប់អារម្មណ៍ពីអ្នកដែលក្ដៅភ្នែកគេ ហើយមានស៊ៃត្វននៅជាមួយ។ គ្មានអ្វីអាចរារាំងបាន(ទោះដោយការហ្សីកៀរ និងសឡាត និងអ្វីផ្សេងទៀត)។ មានហាទីសបញ្ជាក់ពីរឿងនេះ(ជំងឺក្ដៅភ្នែកគឺជាការពិត) រីវ៉ាយ៉ាត់អាល់ពូខរីយ៍។ រីវ៉ាយ៉ាត់មួយផ្សេងទៀត (ស៊ៃត្វននៅជាមួយវា ហើយឈ្នានីសមនុស្សលោក) រីវ៉ាយ៉ាត់អះម៉ាត់។ ហើយអាល់ហៃសាមីយ៍ចាត់ទុកជាហាទីសសហេស ហើយក៏មានសាក្សីជាច្រើនផងដែរ។ គេប្រើបញ្ញត្តិ"ភ្នែក"ព្រោះវាជាឧបករណ៍សម្រាប់ពណ៌នា មិនមែនធ្វើឱ្យមានគ្រោះថ្នាក់ទេ ដោយភស្តុតាងបញ្ជាក់ថា មនុស្សពិការភ្នែកអាចធ្វើឱ្យអ្នកដទៃគ្រោះថ្នាក់ដែរ ដ្បិតគេមិនអាចមើលឃើញ។

[2] السحر គឺជាចំណងឬខ្សែកថាដែលគេសូត្រផ្លុំដាក់ក្នុងវាឬធ្វើឱ្យអ្នកដែលត្រូវបានគេដាក់ធ្មប់




**១.ត្រូវដឹងពីកន្លែងគេដាក់មន្តអាគម:** បើសិនជាគេឃើញ គេត្រូវដោះខ្សែគាថានោះចេញហើយសូត្រស៊ូរ៉ោះ(قُلْ أَعُوذُ)ទាំងពីរ រួចហើយដុតវាចោល។

**២.ព្យាបាលដោយសូត្ររុកយ៉ះបែបឥស្លាម:** សូត្រអាល់គួរអាន ជាពិសេសស៊ូរ៉ោះ (قُلْ أَعُوذُ) ទាំងពីរ និងសូរ៉ោះអាល់ហ្គាករ៉ោះ(البقرة) និងទូអា ដែលមាននៅទំព័រខាងមុខ។

**៣.ណុសរ៉ោះ:** មានពីរប្រភេទ:

**ក.ហារ៉ាម:** ដោះអំពើដោយអំពើ ហើយទៅរកគ្រូអំពើមន្តអាគមឱ្យដោះអំពើនោះ។

**ខ.គេអនុញ្ញាត:** ដូចជា(យកស្លឹកពុទ្រាចំនួនប្រាំពីរសន្លឹក ហើយបុកនឹងដុំថ្មពីរដុំ រួចហើយសូត្រស៊ូរ៉ោះ (الكافرون) ស៊ូរ៉ោះ(الإخلاص) សូរ៉ោះ (الفلق) និងសូរ៉ោះ(الناس) ចំនួនបីដង។ បន្ទាប់មកលាយវាជាមួយទឹក។ រួចឱ្យអ្នកត្រូវអំពើនោះផឹក និងមុជទឹក។ ត្រូវធ្វើដូចនេះដដែលៗរហូតដល់ជា (إن شاء الله) ។ស្រង់ចេញពីសៀវភៅស្នាដៃរបស់លោក អាប់ឌុររ៉ហ្សាក ។

**៤.ដកអំពើចេញ:** សម្អាតដោយថ្នាំបញ្ចុះបើសិនជាវានៅក្នុងពោះ និងដោយជប់យកឈាមអាក្រក់[1] បើសិនជាវានៅកន្លែងផ្សេងក្រៅពីពោះ។

**រុកយ៉ះ(យ័ន្តបែបឥស្លាម) : លក្ខខណ្ឌរបស់វា :**

១. ត្រូវដាក់ឈ្មោះអល់ឡោះ និងស៊ីហ្វាត ឬលក្ខណៈសម្បត្តិទ្រង់។

២. ជាភាសារអារ៉ាប់ ឬភាសារណាដែលគេយល់ន័យរបស់វា។

៣.ត្រូវមានជំនឿថា រុកយ៉ះ ឬយ័ន្តនោះពុំមានឥទ្ធិពលអ្វីទេ តែការជាពីជំងឺនោះគឺមកអំពីអល់ឡោះជាម្ចាស់។

ដើម្បីបង្កើនឥទ្ធិពលរបស់វាគប្បីសូត្រអាល់គួរអានដោយចិត្តប្រាថ្នាចង់ជា និងទទួលបាននូវសេចក្តីចង្អុលបង្ហាញសម្រាប់មនុស្ស និងជិន។ គម្ពីរអាល់គួរអានគេបញ្ចុះមកដើម្បីជាសេចក្តីចង្អុលបង្ហាញ និងសម្រាប់ព្យាបាលឱ្យជា។ គេពុំត្រូវសូត្រដោយប្រាថ្នាចង់សម្លាប់ជិន លើកលែងតែនៅពេលដែលអសមត្ថភាពដេញវាចេញដោយការសូត្រខាងលើ។

---

វង់គ្រោះដល់ខ្លួនប្រាណឬចិត្ត ឬប្រាជ្ញាតែម្តង ហើយវាមានជាតុពិតរបស់វា អ្នកខ្លះត្រូវបានស្លាប់ អ្នកខ្លះមានជំងឺ ខ្លះទៀតមិនអាចរួមសង្វាស់ជាមួយប្រពន្ធរបស់គេបាន អ្នកខ្លះលែងលះគ្នា អ្នកខ្លះសើរិកនិងកូហ្ស អ្នកខ្លះអាចធ្ងន់ធ្ងរខ្លាំង។

[1]ណាពីបានមានប្រសាសថា (ពិតប្រាកដណាស់ ថ្នាំព្យាបាលដ៏ល្អដែលពួកអ្នកប្រើប្រាស់វានោះគឺការជប់ខ្យល់។អល់ឡោះបានឱ្យជំងឺសារីរាង ជំងឺឈ្លានីស ឬជំងឺធ្មប់ដូចជាជំងឺមហារីកជាគេអនុញ្ញាតស្មើយដោយសារការជប់ខ្យល់ និងជំងឺផ្សេងៗជាច្រើនទៀត ដែលកើតមានជាក់ស្តែង។



**លក្ខខណ្ឌរបស់គ្រូព្យាបាលអំពើ : ១.** ចាំបាច់ត្រូវតែជាបុគ្គលមូស្លីម ជាមនុស្សល្អ ត្រឹមត្រូវ និងជាអ្នកកោតខ្លាចចំពោះអល់ឡោះ។ ដរាបណាអ្នកនោះកាន់តែកោតខ្លាចខ្លាំង(តឹកវ៉ា) ដរាបនោះគេមានឥទ្ធិពលកាន់តែខ្លាំង។

**២.** ត្រូវតម្រង់ចិត្តឆ្ពោះទៅអល់ឡោះដោយសេចក្តីស្មោះត្រង់ នៅពេលកំពុងព្យាបាល ដោយប្រមូលផ្តុំរវាងចិត្តនិងអណ្តាតរបស់គេ។ ប្រសើរបំផុត គឺអ្នកជំងឺនោះព្យាបាលដោយខ្លួនឯង។ ពីព្រោះអ្នកដទៃ ចិត្តរបស់គេតែងតែមិនស្ងប់ស្ងល់ រវល់គិតនឹងរឿងផ្សេងៗ។ម្យ៉ាងទៀត គ្មាននរណាម្នាក់មានអារម្មណ៍ដឹងពីគ្រោះអាសន្ន និងតម្រូវការរបស់ខ្លួនជាងខ្លួនឯងនោះទេ។ អ្នកដែលត្រូវមានគ្រោះអាសន្នគឺអល់ឡោះសន្យាថានឹងទទួលយកទូអារបស់គេ។

**លក្ខខណ្ឌអ្នកជំងឺដែលទទួលការព្យាបាល :**

**១.** ជាការប្រសើរបំផុតគឺគេជាអ្នកមូស្លីមត្រឹមត្រូវ។ ឥទ្ធិពលខ្លាំងនៃការព្យាបាលនេះអាស្រ័យលើកម្រិតនៃជំនឿរបស់គេ។ អល់ឡោះជាម្ចាស់បានបន្ទូលថា៖ ﴿ وَنُنَزِّلُ مِنَ ٱلْقُرْءَانِ مَا هُوَ شِفَآءٌ وَرَحْمَةٌ لِّلْمُؤْمِنِينَ وَلَا يَزِيدُ ٱلظَّٰلِمِينَ إِلَّا خَسَارًا ﴾ មានន័យថា: «**យើងបញ្ចុះគម្ពីរអាល់គួរអានដែលមានឱសថព្យាបាល ហើយជាក្តីមេត្តាសម្រាប់ពួកអ្នកមានជំនឿ ហើយទ្រង់មិនបន្ថែមអ្វីសម្រាប់ពួកអ្នកប្រព្រឹត្តអំពើអយុត្តិធម៌នោះក្រៅពីការខាតបង់**»។(អាល់អ៊ីសរ៉ក : ៨២)

**២.** ត្រូវតម្រង់ចិត្តឆ្ពោះទៅអល់ឡោះដោយសេចក្តីស្មោះត្រង់ប្រាថ្នាចង់ឱ្យប្រទាននូវការព្យាបាលឱ្យបានជា។

**៣.** មិនត្រូវតក់ក្រហល់ឆាប់ចង់បានជា។ ពីព្រោះយ័ន្តក្នុងឥស្លាម ឬរុកយ៉ះគឺការទូអា។ បើសិនជាគេប្រញាប់ចង់ឆាប់ជា ជួនកាលគេមិនទទួលយកការបួងសួងរបស់គេ។ ដូចរ៉សូលុលឡោះបានមានប្រសាសន៍ថា: មានន័យថា: «**គេទទួលយកទូអារបស់បុគ្គលណាម្នាក់ ដរាបណាបុគ្គលនោះមិនតក់ក្រហល់។ គេនិយាយថា ខ្ញុំបានសុំទូអាដែរ តែគេមិនទទួលយកទូអារបស់ខ្ញុំ**»។(អាល់ពូខរី និងមូស្លីម)

**វិធីព្យាបាលមានច្រើនបែប :**

**១.** សូត្ររុកយ៉ះជាមួយនឹងការផ្លុំ(គឺស្តោះទឹកមាត់តិចៗ)។ **២.** សូត្រដោយគ្មានការផ្លុំ។ **៣.** យកម្រាមដៃលាបទឹកមាត់ ហើយជ្រលក់ជាមួយនឹងធូលី ហើយយកទៅលាបចំកន្លែងឈឺ។ **៤.** សូត្ររុកយ៉ះជាមួយនឹងការស្ទាបចំកន្លែងដែលឈឺ។

**អាយ៉ាត់និងហាទីសសម្រាប់សូត្រព្យាបាលអ្នកជំងឺ:**(សូរ៉ោះហ្វាទីហះ) (អាយ៉ាត់គួរស៊ី) (ពីរអាយ៉ាត់ចុងក្រោយនៃសូរ៉ោះអាល់ហ្គាករ៉ោះ)
(សូរ៉ោះអាល់កាហ្វីរូន) (អាល់អៀខ្លើស) (អាល់ហ្វាឡឹក) (អាន់ណើស)។សូត្រ
﴿ ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ٱلْحَىُّ ٱلْقَيُّومُ لَا تَأْخُذُهُۥ سِنَةٌ وَلَا نَوْمٌ لَّهُۥ مَا فِى ٱلسَّمَٰوَٰتِ وَمَا فِى ٱلْأَرْضِ مَن

ذَا ٱلَّذِى يَشۡفَعُ عِندَهُۥٓ إِلَّا بِإِذۡنِهِۦۚ يَعۡلَمُ مَا بَيۡنَ أَيۡدِيهِمۡ وَمَا خَلۡفَهُمۡۖ وَلَا يُحِيطُونَ بِشَيۡءٖ مِّنۡ عِلۡمِهِۦٓ
إِلَّا بِمَا شَآءَۚ وَسِعَ كُرۡسِيُّهُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَۖ وَلَا يَـُٔودُهُۥ حِفۡظُهُمَاۚ وَهُوَ ٱلۡعَلِيُّ ٱلۡعَظِيمُ ﴾
﴿ ءَامَنَ ٱلرَّسُولُ بِمَآ أُنزِلَ إِلَيۡهِ مِن رَّبِّهِۦ وَٱلۡمُؤۡمِنُونَۚ كُلٌّ ءَامَنَ بِٱللَّهِ وَمَلَٰٓئِكَتِهِۦ وَكُتُبِهِۦ وَرُسُلِهِۦ لَا
نُفَرِّقُ بَيۡنَ أَحَدٖ مِّن رُّسُلِهِۦۚ وَقَالُواْ سَمِعۡنَا وَأَطَعۡنَاۖ غُفۡرَانَكَ رَبَّنَا وَإِلَيۡكَ ٱلۡمَصِيرُ ٢٨٥ لَا
يُكَلِّفُ ٱللَّهُ نَفۡسًا إِلَّا وُسۡعَهَاۚ لَهَا مَا كَسَبَتۡ وَعَلَيۡهَا مَا ٱكۡتَسَبَتۡۗ رَبَّنَا لَا تُؤَاخِذۡنَآ إِن نَّسِينَآ أَوۡ
أَخۡطَأۡنَاۚ رَبَّنَا وَلَا تَحۡمِلۡ عَلَيۡنَآ إِصۡرٗا كَمَا حَمَلۡتَهُۥ عَلَى ٱلَّذِينَ مِن قَبۡلِنَاۚ رَبَّنَا وَلَا تُحَمِّلۡنَا مَا لَا
طَاقَةَ لَنَا بِهِۦۖ وَٱعۡفُ عَنَّا وَٱغۡفِرۡ لَنَا وَٱرۡحَمۡنَآۚ أَنتَ مَوۡلَىٰنَا فَٱنصُرۡنَا عَلَى ٱلۡقَوۡمِ ٱلۡكَٰفِرِينَ ﴾
﴿ فَسَيَكۡفِيكَهُمُ ٱللَّهُۚ وَهُوَ ٱلسَّمِيعُ ٱلۡعَلِيمُ ﴾ 1
﴿ يَٰقَوۡمَنَآ أَجِيبُواْ دَاعِيَ ٱللَّهِ وَءَامِنُواْ بِهِۦ يَغۡفِرۡ لَكُم مِّن ذُنُوبِكُمۡ وَيُجِرۡكُم مِّنۡ عَذَابٍ أَلِيمٖ ﴾ 2
﴿ وَنُنَزِّلُ مِنَ ٱلۡقُرۡءَانِ مَا هُوَ شِفَآءٞ وَرَحۡمَةٞ لِّلۡمُؤۡمِنِينَ وَلَا يَزِيدُ ٱلظَّٰلِمِينَ إِلَّا خَسَارٗا ﴾ 3
﴿ وَإِذَا مَرِضۡتُ فَهُوَ يَشۡفِينِ ﴾ 45 ﴿ أَمۡ يَحۡسُدُونَ ٱلنَّاسَ عَلَىٰ مَآ ءَاتَىٰهُمُ ٱللَّهُ مِن فَضۡلِهِۦۖ 6
﴿ قُلۡ هُوَ لِلَّذِينَ ءَامَنُواْ هُدٗى وَشِفَآءٞۚ ﴾ 7 ﴿ وَيَشۡفِ صُدُورَ قَوۡمٖ مُّؤۡمِنِينَ ﴾
﴿ لَوۡ أَنزَلۡنَا هَٰذَا ٱلۡقُرۡءَانَ عَلَىٰ جَبَلٖ لَّرَأَيۡتَهُۥ خَٰشِعٗا مُّتَصَدِّعٗا مِّنۡ خَشۡيَةِ ٱللَّهِۚ ﴾ 8
﴿ فَٱرۡجِعِ ٱلۡبَصَرَ هَلۡ تَرَىٰ مِن فُطُورٖ ﴾ 9

---

[1] (ដូច្នេះគ្រប់គ្រាន់ហើយដែលមាន អល់ឡោះការពារអ្នកពីពួកគេ។ ហើយទ្រង់មហាឮ មហាដឹង)។(អាល់ហ្គោគរ៉ោះ : ១៣៧)

[2] (ឱក្រុមរបស់ពួកយើង! ចូរពួកអ្នកឆ្លើយតបចំពោះអ្នក អំពាវនាវរបស់អល់ឡោះ (មូហាំម៉ាត់) និងមានជំនឿលើគេចុះ ទ្រង់ នឹងអភ័យទោសដល់ពួកអ្នកនូវទោសកំហុសទាំងឡាយរបស់ពួកអ្នក ហើយទ្រង់នឹងសង្គ្រោះពួកអ្នកឱ្យរួចផុតពីទារុណកម្មដ៏ឈឺចាប់)។ (អាល់អះក៏ហ្វ : ៣១)

[3](ហើយយើងបញ្ចុះ(ឱ្យអ្នក)អំពីគម្ពីរគួរអានដែលវាជាការ ព្យាបាល ហើយជាការប្រោសប្រណីសម្រាប់បណ្ដាអ្នកដែលមាន ជំនឿ ហើយទ្រង់មិនបន្ថែមឱ្យពួកដែលបំពានក្រៅពីការខាតបង់ នោះឡើយ)។ (អាល់អ៊ីសរ៉ក : ៨២)

[4](ឬមួយក៏ពួកគេច្រណែនឈ្នានីសនឹងមនុស្សដទៃចំពោះអ្វី ដែលអល់ឡោះបានប្រទានឱ្យពួកគេ (មូហាំម៉ាត់ និងសហាហ្ពះ) អំពីការប្រោសប្រទានរបស់ទ្រង់?)។(អាន់ណីសាក : ៥៤)

[5] (ហើយនៅពេលខ្ញុំមានជម្ងឺ គឺទ្រង់ជាអ្នកដែលធ្វើឱ្យខ្ញុំជាសះ ស្បើយ)។(អាស្ហូស្ហូអរ៉ក: ៨០)

[6] (ព្រមទាំងធ្វើឱ្យរំសាយកង្វល់ពីក្នុងចិត្តរបស់ក្រុមដែលមានជំនឿ)។(អាត់តៅហ្ពះ: ១៤)

[7] (ចូរអ្នក(មូហាំម៉ាត់)ពោល ថាៈ វាគឺជាការចង្អុលបង្ហាញ និងជាឱសថព្យាបាលសម្រាប់បណ្ដា អ្នកដែលមានជំនឿ។)។(ហ្វូស្ស៊ីឡាត់ : ៤៤)

[8](ប្រសិនបើយើងបញ្ចុះគម្ពីរគួរអាននេះទៅលើភ្នំណាមួយ អ្នកពិតជានឹងឃើញភ្នំនោះឱនលំទោនរហូតដល់បែកជាបំណែក ដោយសារខ្លាចអល់ឡោះ។)។ (អាល់ហាស្ហរ៍ : ២១)

[9] (ដូច្នេះចូរអ្នកក្រឡេកមើលម្ដងទៀត តើអ្នក ឃើញមានកន្លែងប្រេះស្រាំដែរឬទេ?)។ (អាល់មុលក៍ : ៣)



﴿ وَإِن يَكَادُ ٱلَّذِينَ كَفَرُواْ لَيُزْلِقُونَكَ بِأَبْصَٰرِهِمْ لَمَّا سَمِعُواْ ٱلذِّكْرَ وَيَقُولُونَ إِنَّهُۥ لَمَجْنُونٌ ﴾ [1]

﴿ وَأَوْحَيْنَآ إِلَىٰ مُوسَىٰٓ أَنْ أَلْقِ عَصَاكَ ۖ فَإِذَا هِىَ تَلْقَفُ مَا يَأْفِكُونَ ﴿١١٧﴾ فَوَقَعَ ٱلْحَقُّ وَبَطَلَ مَا كَانُواْ يَعْمَلُونَ ﴿١١٨﴾ فَغُلِبُواْ هُنَالِكَ وَٱنقَلَبُواْ صَٰغِرِينَ ﴾ [2]

﴿ قَالُواْ يَٰمُوسَىٰٓ إِمَّآ أَن تُلْقِىَ وَإِمَّآ أَن نَّكُونَ أَوَّلَ مَنْ أَلْقَىٰ ﴿٦٥﴾ قَالَ بَلْ أَلْقُواْ ۖ فَإِذَا حِبَالُهُمْ وَعِصِيُّهُمْ يُخَيَّلُ إِلَيْهِ مِن سِحْرِهِمْ أَنَّهَا تَسْعَىٰ ﴿٦٦﴾ فَأَوْجَسَ فِى نَفْسِهِۦ خِيفَةً مُّوسَىٰ ﴿٦٧﴾ قُلْنَا لَا تَخَفْ إِنَّكَ أَنتَ ٱلْأَعْلَىٰ ﴿٦٨﴾ وَأَلْقِ مَا فِى يَمِينِكَ تَلْقَفْ مَا صَنَعُوٓاْ ۖ إِنَّمَا صَنَعُواْ كَيْدُ سَٰحِرٍ ۖ وَلَا يُفْلِحُ ٱلسَّاحِرُ حَيْثُ أَتَىٰ ﴾ [3]

﴿ ثُمَّ أَنزَلَ ٱللَّهُ سَكِينَتَهُۥ عَلَىٰ رَسُولِهِۦ وَعَلَى ٱلْمُؤْمِنِينَ ﴾ [4]

﴿ فَأَنزَلَ ٱللَّهُ سَكِينَتَهُۥ عَلَيْهِ وَأَيَّدَهُۥ بِجُنُودٍ لَّمْ تَرَوْهَا ﴾ [5]

﴿ فَأَنزَلَ ٱللَّهُ سَكِينَتَهُۥ عَلَىٰ رَسُولِهِۦ وَعَلَى ٱلْمُؤْمِنِينَ وَأَلْزَمَهُمْ كَلِمَةَ ٱلتَّقْوَىٰ ﴾ [6]

---

[1] (ហើយពិតប្រាកដណាស់ ពួកដែលគ្មានជំនឿស្ទើរតែធ្វើឱ្យ អ្នកមានគ្រោះថ្នាក់ដោយសារតែការសម្លឹងមើលរបស់ពួកគេនៅ ពេលដែលពួកគេបានស្តាប់ព្ទគម្ពីរគួរអាន ហើយពួកគេថែមទាំង និយាយថាៈ ពិតប្រាកដណាស់ គាត់គឺជាមនុស្សវិកលចរិត)។(អាល់ក៏ឡាំ : ៥១)

[2](យើងបានផ្តល់វ៉ាហ៊ីទៅកាន់មូសាថាៈ ចូរអ្នកបោះដំបង របស់អ្នកទៅ! (មូសាក៏បានបោះដំបង) រំពេចនោះវាក៏ទៅលេប អ្វីៗដែលពួកគេកំពុងបំភាន់នោះ)១១៧(បន្ទាប់មកការពិតក៏បានលេចឡើង ហើយអ្វីដែលពួក គេបានធ្វើគ្មានប្រសិទ្ធភាពឡើយ)១១៨ (ដូច្នេះពួកគេត្រូវបានបរាជ័យនៅទីនោះ ហើយពួកគេ (ហ្វៀរអោននិងបរិវា)ក៏បានចាកចេញដោយអាម៉ាស់បំផុត)។ (អាល់អាក់រ៉ហ្វ : ១១៧-១១៩)

[13] (ពួកគេក៏បាននិយាយថា ឱមូសា! តើអ្នកបោះ(ដំបង) មុន ឬក៏ពួកយើងបោះមុន) ៦៥ (គាត់(មូសា) បានឆ្លើយថា ទេ! ចូរពួកអ្នកបោះមុនចុះ! រំពេចនោះខ្សែពួរនិងដំបងរបស់ពួកគេចេញពីមន្តអាគមរបស់ ពួកគេ វាធ្វើឱ្យគាត់ឆ្មិនភ្នែកហាក់ដូចជាសត្វពស់កំពុងតែវារ)៦៦(ពេលនោះមូសាមានអារម្មណ៍ភ័យខ្លាចនៅក្នុងខ្លួនរបស់ គាត់)៦៧ (យើង(អល់ឡោះ)បានមានបន្ទូលថាៈ ចូរអ្នកកុំភ័យខ្លាច ពិតប្រាកដណាស់ អ្នកគឺជាអ្នកដែលមានប្រៀបជាងគេ)៦៨(ហើយចូរអ្នកបោះនូវអ្វីដែលមាននៅនឹងដៃស្តាំរបស់ អ្នកចុះ នោះវានឹងលេបត្របាក់នូវអ្វីដែលពួកគេបានធ្វើ។ តាមពិតអ្វីដែល ពួកគេបានធ្វើគឺគ្រាន់តែជាការបោកបញ្ឆោតរបស់គ្រូមន្តអាគម ប៉ុណ្ណោះ។ ហើយគ្រូមន្តអាគមមិនអាចមានជ័យជំនះឡើយ ទោះបី ជាគេមកពីទីណាក៏ដោយ)។(តហើ : ៦៥-៦៩)

[4](ក្រោយមកអល់ឡោះ បានបញ្ចុះភាពនឹងនររបស់ទ្រង់ ទៅលើអ្នកនាំសាររបស់ទ្រង់ និងពួកដែលមានជំនឿ(ឱ្យមាន ស្មារតីប្រយុទ្ធឡើងវិញ)។)។(អាត់តៅហ្ពះ : ២៦)

[5] (ពេលនោះអល់ឡោះ ក៏បានបញ្ចុះភាពនឹងនររបស់ទ្រង់ដល់គេ ហើយជួយពង្រឹងគេដោយ មានកងទ័ព(ម៉ាឡាអ៊ីកាត់)ជាច្រើនដែលពួកអ្នកមើលមិនឃើញ ពួកគេ)។(អាត់តៅហ្ពះ : ៤០)

[6] (អល់ឡោះបានបញ្ចុះភាពនឹងនរទៅលើអ្នកនាំសាររបស់ទ្រង់ និងទៅលើបណ្តាអ្នក

﴿لَّقَدْ رَضِيَ ٱللَّهُ عَنِ ٱلْمُؤْمِنِينَ إِذْ يُبَايِعُونَكَ تَحْتَ ٱلشَّجَرَةِ فَعَلِمَ مَا فِي قُلُوبِهِمْ فَأَنزَلَ ٱلسَّكِينَةَ عَلَيْهِمْ وَأَثَٰبَهُمْ فَتْحًا قَرِيبًا﴾[1]

﴿هُوَ ٱلَّذِيٓ أَنزَلَ ٱلسَّكِينَةَ فِي قُلُوبِ ٱلْمُؤْمِنِينَ لِيَزْدَادُوٓاْ إِيمَٰنًا مَّعَ إِيمَٰنِهِمْ﴾[2]

ហាទីស:

(أَسْأَلُ اللهَ الْعَظِيمَ رَبَّ الْعَرْشِ الْعَظِيمِ أَنْ يَشْفِيَكَ) (អាស់អាលុលឡោះហើលអាហ្ស៊ីម រ៉បពើលអារស្ហ៊ីលអាហ្ស៊ីម អៃយ៉ាស្ហ្វីយ៉ាកើ) ប្រាំពីដង។មានន័យថា៖ ខ្ញុំសុំពីអល់ឡោះជាម្ចាស់ដ៏ធំ ម្ចាស់អារ៉ស្យដ៏ធំធេង សូមទ្រង់ឱ្យអ្នកឆាប់បានជាសះស្បើយ។

(أُعِيذُكَ بِكَلِمَاتِ اللهِ التَّامَّةِ مِنْ كُلِّ شَيْطَانٍ وَهَامَّةٍ وَمِنْ كُلِّ عَيْنٍ لاَمَّةٍ) (អ៊ូអ៊ីហ្សកើ ពីកើលីម៉ាតីលឡើហ៊ីតតាមម៉ះ មីុនគុលលីស្ហៃតន វ៉ាហាមម៉ះ វ៉ាមីុនគុលលីអៃណឹនឡាមម៉ះ)[3]

(اَللَّهُمَّ رَبَّ النَّاسِ أَذْهِبِ الْبَأْسَ اِشْفِ أَنْتَ الشَّافِي لاَ شِفَاءَ إِلَّا شِفَاؤُكَ شِفَاءً لاَيُغَادِرُ سَقَمًا) (អល់ឡោះហុំម៉ារ៉បប៉ានណាស អាហ្សហ៊ីពីលប៉ាក់សើ អ៊ីស្ហ្វីអាន់តាស្ហស្ហ៊ីហ្វី ឡើស្ហ៊ីហ្វាអា អ៊ីលឡើស្ហ៊ីហ្វាអ៊ូកើ ស្ហីហ្វាអាន់ឡើយ៉ូហ្កទីរ៉ូសើក៏ម៉ា)[4]

(اَللَّهُمَّ أَذْهِبْ عَنْهُ حَرَّهَا وَبَرْدَهَا وَوَصَبَهَا) (អល់ឡោះហុំម៉ាអាហ្សហ៊ីពអាន់ហ៊ូ ហាររ៉ាហើ វ៉ាហ្ពាររទើហើ វ៉ាវ៉ាស្ហពើហើ)[5]

(حَسْبِيَ اللهُ لاَ إِلَهَ إِلَّا هُوَ عَلَيْهِ تَوَكَّلْتُ وَهُوَ رَبُّ الْعَرْشِ الْعَظِيمِ) (ហាសពីយ៉ាល់ឡោះហ៊ូឡើ

---

ដែលមានជំនឿ។ ហើយទ្រង់បានដាក់បញ្ញត្តិទៅលើពួកគេនូវពាក្យ កោតខ្លាច )។ (អាល់ហ្វាតហ៍ : ២៦

[1](ជាការពិតណាស់ អល់ឡោះបានយល់ព្រមចំពោះបណ្ដា អ្នកមានជំនឿនៅពេលដែលពួកគេបានធ្វើកិច្ចព្រមព្រៀងជាមួយ អ្នក(មូហាំម៉ាត់)នៅក្រោមដើមឈើ ហើយទ្រង់បានដឹងនូវអ្វីដែល មាននៅក្នុងចិត្តរបស់ពួកគេ និងបានបញ្ចុះភាពនឹងនរទៅលើពួកគេ ហើយទ្រង់ប្រទានឱ្យពួកគេនូវជ័យជំនះក្នុងពេលឆាប់ៗ)។ (អាល់ហ្វាតហ៍ : ១៨)

[2] (ទ្រង់ជាអ្នកដែលបានបញ្ចុះភាពនឹងនរនៅក្នុងចិត្តរបស់បណ្ដា អ្នកដែលមានជំនឿ (នៅថ្ងៃអាល់ហ៊ូទៃពីយ៉ះ) ដើម្បីឱ្យពួកគេបន្ថែម នូវភាពមានជំនឿរួមជាមួយនឹងជំនឿរបស់ពួកគេថែមទៀត)។(អាល់ហ្វាតហ៍ : ៤)

[3] បីដង។មានន័យថា៖ ខ្ញុំសូមពីអល់ឡោះដោយពាក្យពេចន៍របស់ទ្រង់ដ៏ពេញលេញសូមបញ្ចៀសរូបគេពីស្ហៃតនអំពើអាក្រក់ និងរាល់ឥទ្ធិពលនៃជំងឺភ្នែកក្ដៅភ្នែក។

[4] បីដង។មានន័យថា៖ ឱអល់ឡោះជាម្ចាស់នៃមនុស្សលោក! សូមទ្រង់បំបាត់ជម្ងឺនេះ និងឱ្យគាត់បានជាសះស្បើយផង ទ្រង់គឺជាអ្នកមានលទ្ធភាពធ្វើឱ្យជា គ្មានអ្នកណាមានលទ្ធភាពក្រៅពីទ្រង់ដែលអាចធ្វើឱ្យជាទាំងស្រុងពីជំងឺទាំងពួងឡើយ។

[5] ម្ដង។មានន័យថា៖( ឱអល់ឡោះជាម្ចាស់ សូមទ្រង់បំបាត់អំពីគេផងចុះនូវភាពក្ដៅរបស់វា ភាពត្រជាក់របស់វា និងភាពទន់ខ្សោយរបស់វា។



អ៊ីទ្បីហើអ៊ីលទ្បីហ៊្វវាអាឡៃហ៊ីតាវ៉ាកកិលតួវាហ៊្វវ៉ាប៉ពូលអារស៊ីលអាហ្ស៊ីម)[1]
(بِسْمِ اللهِ أَرْقِيْكَ مِنْ كُلِّ دَاءٍ يُؤْذِيْكَ وَمِنْ شَرِّ كُلِّ نَفْسٍ أَوْ عَيْنٍ حَاسِدٍ، اللهُ يَشْفِيْكَ بِسْمِ اللهِ أَرْقِيْكَ)
(ពិសមីលទ្បីហ៊ីអារកីកើ មីនគុលលីស្ទែអ៊ីនយូកស៊ីកើ មីនស៊ើររីគុលលីណាហ្សិន អៅអៃនិនហាស៊ីទិន អល់ឡោះហ្វយ៉ាសហ្វីកើ ពិសមីលទ្បីហ៊ីអួរកីកើ)[2]
អល់ឡោះគឺជាអ្នកព្យាបាលអ្នកហើយនឹងនាម អល់ឡោះខ្ញុំសូត្រព្យាបាលអ្នក។ ដាក់ដៃរបស់អ្នក លើកន្លែងឈឺហើយសូត្រ «بسم الله» (ពិសមីលទ្បីហ៍)បីដង និងសូត្រ «أَعُوْذُ بِعِزَّةِ اللهِ وَقُدْرَتِهِ مِنْ شَرِّ مَا أَجِدُ وَأُحَاذِرُ» (អាអូហ្សូពីអ៊ីហ្សហ្សើតីលទ្បីហ៊ី វាកុទរ៉ាតីហ៊ី មិនស៊ើររីម៉ាអាជីទូ វាអូហាហ្ស៊ីរ៉ូ) ប្រាំពីដង។មានន័យថា៖ ខ្ញុំសុំពីភាពឧត្តុង្គឧត្តមរបស់អល់ឡោះ និងអានុភាពរបស់ទ្រង់ ឱ្យបញ្ចៀសខ្ញុំអំពីប្រការអាក្រក់ដែលខ្ញុំមាន និងពីអ្វីដែលខ្ញុំខ្លាច។

កំណត់សម្គាល់ :

១.គេមិនអនុញ្ញាតឱ្យជឿលើរឿងអប្បិយជំនឿទាក់ទងនឹងជំងឺក្ដៅភ្នែក ដូចជាព្យាបាលដោយផឹកទឹកនោម ហើយវាអស់ឥទ្ធិពលបើសិនជាអ្នកផឹកដឹងថាវាជាទឹកនោម។

២.គេមិនអនុញ្ញាតឱ្យពាក់ខ្សែកថាធ្វើពីស្បែក ខ្សែដៃ និងខ្សែក ដើម្បីការពារកុំឱ្យត្រូវអំពើក្ដៅភ្នែក។ រ៉ស៊ូលុលឡោះបានមានប្រសាសន៍ថា: មានន័យថា: «អ្នកណាពាក់អ្វីមួយគឺគេប្រគល់អ្នកនោះឱ្យទៅរបស់នោះ(មានន័យថា អល់ឡោះទ្រង់មិនជួយអ្នកនោះឡើយ)។(អាត់តៀរមីហ្ស៊ី)

តែបើសិនជា ពាក់អ្វីដែលមានអាយ៉ាត់អាល់គួរអាន គឺមានការខ្វែងយោបល់គ្នារវាងសាសនវិទូឥស្លាម ហើយបើបោះបង់ជាការប្រសើរ។

៣\សរសេរពាក្យ «ماشاء الله تبارك الله» ឬគូររូបដាវ ឬកាំបិត ឬភ្នែក ឬដាក់អាយ៉ាត់អាល់គួរអាននៅក្នុងឡាន ឬព្យួរអាយ៉ាត់គួរអាននៅក្នុងផ្ទះ ប្រការទាំងអស់នោះមិនអាចការពារអំពើក្ដៅភ្នែកបានឡើយ។ជួនកាល អាចចូលជាលក្ខណៈខ្សែកថាដែល គេហាមឃាត់។

៤.អ្នកជំងឺត្រូវជឿជាក់ថាគេនឹងទទួលយកការសូត្ររុកយ៉ះរបស់ខ្លួន មិនត្រូវមាន

---

[1] ប្រាំពីរដង។ មានន័យថា៖ មានតែអល់ឡោះមួយគត់ គឺគ្រប់គ្រាន់ ហើយសម្រាប់រូបខ្ញុំ។ គ្មានទេម្ចាស់ដែលត្រូវគោរពយ៉ាងពិតប្រាកដ គឺមានតែអល់ឡោះដែលខ្ញុំសូមប្រគល់ខ្លួនជូនទាំងស្រុង ហើយអល់ឡោះគឺជាម្ចាស់អារ៉ហ្សដ៏ធំធេង។

[2] បីដង។មានន័យថា៖ នឹងនាមអល់ឡោះ ខ្ញុំសូត្រព្យាបាលអ្នក អំពីរាល់ប្រការអាក្រក់ដែលធ្វើប៉ះពាល់ ដល់អ្នក និងអំពីប្រការអាក្រក់នៃបុគ្គលទាំងឡាយ ប្រការអាក្រក់ដែលបង្ក ដោយភ្នែករបស់អ្នកឈ្នានីស។




ចិត្តតក់ក្រហល់។ បើសិនជាគេប្រាប់ថា អ្នកត្រូវបានព្យាបាលដោយប្រើថ្នាំពេញមួយជីវិតគឺអ្នកនោះគ្មានការព្រួយបារម្ភនោះទេ។ ក៏ប៉ុន្តែគេព្រួយចិត្តបើសិនជាត្រូវព្យាបាលយូរដោយរុកយ៉ះ។ ដ្បិតរាល់ពេលដែលគេសូត្រមួយតួអក្សរ គេទទួលបានផលបុណ្យមួយ ហើយផល បុណ្យកើនឡើងទ្វេជាដប់។ ដូច្នេះ គេត្រូវទូអា និងសុំការអភ័យទោស ហើយបរិច្ចាគធ្វើទានឱ្យបានច្រើន។ ព្រោះវាជាចំណែកមួយនៃការព្យាបាលជំងឺ។

៥.សូត្ររួមគ្នាជាប្រការដែលផ្ទុយនឹងស៊ុណ្ណះ ហើយមានឥទ្ធិពលតិចតួច។ ដូចគ្នាដែរ ការចាក់ម៉ាញ៉េស្តាប់។ ដោយសារការតាំងចិត្ត(នៀត) ពុំបានសម្រេចដោយការធ្វើដូច្នេះនោះទេ។ ពីព្រោះនៀតគឺជាលក្ខខ័ណ្ឌសម្រាប់អ្នកព្យាបាលដោយរុកយ៉ះ។ ដ្បិតតែការស្តាប់ក៏ជាប្រការមួយល្អប្រសើរដែរ។ សូណាត់ឱ្យសូត្ររុកយ៉ះនេះដដែលៗ បើសិនជានឿយហត់ អាចបន្ថយបានកុំឱ្យគេធុញទ្រាន់។ រីឯការកំណត់ចំនួនប៉ុន្មានដងក្នុងការសូត្រអាយ៉ាត់ និងទូអាគឺពុំត្រូវធ្វើទេ លុះត្រាតែមានអំណះអំណាង(دليل)។

៦.នៅមានសញ្ញាសម្គាល់ផ្សេងៗ មួយចំនួនដែលអាចសន្និដ្ឋានបានថា អ្នកព្យាបាលអំពើនោះប្រើប្រាស់មន្តអាគម មិនមែនប្រើអាល់គួរអាន។ កុំចាញ់បោកគេដោយគ្រាន់តែរូបភាពខាងក្រៅ ដែលគេបង្ហាញពីរូបភាពសាសនា។ ជួនកាលគេអាចចាប់ផ្តើមដោយសូត្រអាល់គួរអាន តែមិនយូរប៉ុន្មានគេអាចប្តូរទៅប្រើមន្តអាគមផ្សេងវិញ។ ជួនកាលគេអាចជាមនុស្សឧស្សាហ៍ទៅម៉ាស្ជិតដើម្បីបំភាន់ភ្នែកមនុស្ស។ ជួនកាលអ្នកឃើញគេហ្សីកៀរច្រើននៅចំពោះមុខអ្នក។ អ្នកមិនត្រូវចាញ់បោកគេនោះទេ។ ចូរប្រុងប្រយ័ត្ន!

### សញ្ញាសម្គាល់មួយចំនួនរបស់គ្រូមន្តអាគមនិងជនបោកប្រាស់ :

- ❖ សួរឈ្មោះអ្នកជំងឺ ឬឈ្មោះម្តាយអ្នកជំងឺ។ ពីព្រោះថាការស្គាល់ឈ្មោះឬមិនស្គាល់ វាមិនអាចផ្លាស់ប្តូរការព្យាបាលនោះឡើយ។
- ❖ សុំអ្វីមួយពីសម្លៀកបំពាក់របស់អ្នកជំងឺ ដូចជាអាវ ឬអាវយឺត។
- ❖ គេអាចទារសត្វអ្វីមួយដែលមានលក្ខណៈណាមួយជាក់លាក់ពីអ្នកជំងឺដើម្បីឱ្យគេសម្លេះសែនឱ្យជិន។ ជួនកាលអាចយកឈាមសត្វនោះទៅលាបលើអ្នកជំងឺ។
- ❖ សរសេរ ឬសូត្រមន្តអាគមដែលគេមិនយល់ហើយអត់មានអត្ថន័យ។
- ❖ ឱ្យក្រដាសមានគូររូបបួនជ្រុងដែលមានសរសេរអក្សរ ឬលេខទៅអ្នកជំងឺ គេហៅថា (អាល់ហ៊ីហ្សាប)។
- ❖ ប្រើអ្នកជំងឺឱ្យនៅម្នាក់ឯងមួយរយៈ នៅក្នុងបន្ទប់ងងឹត គេហៅថា(អាល់ហិចហ្ពះ)
- ❖ ប្រើអ្នកជំងឺមិនឱ្យប៉ះទឹករយៈពេលមួយកំណត់។



❖ ឱ្យអ្វីមួយទៅអ្នកជំងឺយកទៅកប់ក្នុងដី ឬដុតក្រដាស ហើយស្រូបយកចំហាយរបស់វា។
❖ ឱ្យអ្នកជំងឺប្រាប់គេអំពីចំណុចពិសេសរបស់អ្នកជំងឺមួយចំនួនដែលគ្មាននរណាម្នាក់ដឹង ឬឈ្មោះរបស់អ្នកជំងឺ និងប្រទេសរបស់គេ និងជំងឺរបស់គេមុននឹងគេនិយាយ។
❖ ពិនិត្យស្ថានភាពអ្នកជំងឺដោយគ្រាន់តែចូលទៅជួបអ្នកជំងឺ ឬនិយាយតាមទូរស័ព្ទ ឬតាមរយៈប្រៃសណីយ៍។

៧. និកាយអះលីស៊ុណ្ណះថាជិនអាចចូលសណ្ឋិតក្នុងខ្លួនមនុស្ស។ ភស្តុតាងបញ្ជាក់ដោយព្រះបន្ទូលរបស់ទ្រង់ថា: មានន័យថា: «**ពួកអ្នកដែលស៊ីប្រាក់ការនោះ មិនអាចក្រោកឡើងនៅថ្ងៃបរលោកបានទេលើកលែងតែដូចអ្នកដែលស្ែរតួនចូលសណ្ឋិត**»។ (អាល់ហ្គោគរ៉ោះ : ២៧៥)

ពួកអ្នកតាហ្វសៀរបានឯកភាពគ្នាថាពាក្យ«المس»មានន័យថា ឆ្កួតដូចស្ែរតួនដែលលែងមានតម្លៃជាមនុស្សដោយសារជិនចូលសណ្ឋិត។

**បន្ថែម : មន្តអាគម:** គឺមានពិត ហើយស្លាកស្នាមរបស់វាគឺមាននៅក្នុងគម្ពីគួរអាន និងហាឌីស ហើយវាជាប្រការហារ៉ម យ៉ាងធ្ងន់ធ្ងរ និងធំធេងជាទីបំផុត។ដូចជារ៉សូលុលឡោះបានមានប្រសាសន៍ថា៖ មានន័យថា៖ **ចូរ ពួកអ្នកជៀសវាងពីប្រាំពីរប្រការដែលនាំអោយអន្តរាយ**"។ ពួកគេបានសួរថា : ឱ រ៉ស៊ូលុលឡោះ ! តើវាគឺអ្វីខ្លះ? លោកបានឆ្លើយថា : " **គឺការធ្វើស៊ីរិកចំពោះ អល់ឡោះ ការប្រើមន្តអាគម** ........)។ (អាល់ពូខរី និងមូស្លីម)

មានន័យថា៖ **ហើយជាការ ពិតណាស់ ពួកគេបានដឹងថា អ្នកណាបានជ្រើសរើសយកមន្តអាគម នឹងគ្មានផលល្អទេនៅថ្ងៃបរលោក។**(អាល់ហ្គោគរ៉ោះ : ១០២)

ហើយវាមានពីរផ្នែក៖ ១/កត់ត្រាលើក្រដាស់ដើម្បីឱ្យគ្រូមន្តអាគមធ្វើការទំនាក់ទំនងប្រើប្រាសស្ែរតួន ឱ្យផ្តលគ្រោះថ្នាក់អ្វីដែលគេចង់ទៅដល់អ្នកត្រូវមន្តអាគម។ ២/ថ្នាំដែលផ្តល់ផលប៉ះពាល់ដល់រាងកាយអ្នកត្រូវមន្តអាគម សតិ ឆន្ទះ និងទំនោចិត្តរបស់គាត់។ដែលគេហៅថា៖ អាហស្វារហ្វ៍ និងអាល់អត់ហ្វ៍។ ដោយធ្វើឱ្យអ្នកដែលត្រូវអាគមស្រមើលស្រមៃឃើញអ្វីម្យ៉ាងក្រឡាប់ ឬកំរើក ឬដើរ ឬអ្វីដែលស្រដៀងនេះ។ទីមួយទង្វើរបស់វាគឺស៊ីរិក ពីព្រោះស្ែរតួនវាមិនធ្វើតាមគ្រូមន្តអាគមទេលើកលែងតែ គេគូហ្វរ(ប្រឆាំង)នឹងអល់ឡោះ។ចំណែកឯទីពីរវាគឺប្រការអន្តរាយ និងជាអំពើបាបដ៏ធំមួយក្នុងចំណោមអំពើបាបធំៗ។ហើយទាំងអស់វានោះអាចកើតឡើងបានដោយសារការកំណត់របស់អល់ឡោះប៉ុណ្ណោះ។

ផលប្រយោជន៍ : ១.តើជិនជាអ្វី? ពួកគេជាសត្វលោកមួយក្នុងចំណោមសត្វ




លោកទាំងឡាយរបស់អល់ឡោះ។ ពួកគេមានកំណើតពីភ្លើង។ ចំណែកឯពួកទេវតាគេបង្កើតពីពន្លឺ។ ពួកគេទាំងអស់នោះត្រូវមានកាតព្វកិច្ចរួម ហើយទ្រង់មិនបានចាត់តាំងណាពីណាម្នាក់មុនណាពីមូហាំម៉ាត់ទៅកាន់ពួកគេនោះទេ។ ពួកគេក៏មិនមែនជាណាពី ហើយក៏មិនមែនជារ៉សូលដែរ។ ពួកជិនកាហ្វៀរចូលឋាននរក ហើយពួកជិនមានជំនឿចូលក្នុងឋានសួគ៌។ ពួកគេមិនត្រូវបានក្លាយជាដីឡើយ។ ពួកគេចូលឋានសួគ៌តាមទង្វើរបស់ពួកគេ លើកលែងតែពួកគេបានកែប្រែទង្វើរបស់ខ្លួន។ ពួកគេចេះទទួលទានអាហារផឹកទឹកនៅក្នុងឋានសួគ៌ ។អ៊ីម៉ាំតាកីយុទ្ទីនបាននិយាយថា : នៅក្នុងឋានសួគ៌យើងមើលឃើញពួកគេតែពួកគេមើលមិនឃើញយើងទេ។

២.ការឈ្នានីស : គឺជាការស្រមៃចង់ឱ្យអ្នកដទៃបាត់បងលាភសក្ការៈ។ ភាគច្រើនវាកើតឡើងមកពីការក្តៅភ្នែក។ វាគឺជាអំពើបាបកម្រិតធ្ងន់ មិនត្រឹមតែប៉ុណ្ណោះវាជាគ្រឹះនៃអំពើបាបកម្រិតធ្ងន់ ហើយវាជាអំពើល្មើសដំបូងបង្អស់ចំពោះអល់ឡោះ។ អ៊ិបលីសបោះបង់ការស៊ូជោតចំពោះអាដាំដោយការឈ្នានីសចំពោះអាដាំ។ ម្យ៉ាងទៀតកពីលសម្លាប់ប្អូនរបស់ខ្លួនដោយសារមូលហេតុនេះដែរ។

**វិធីព្យាបាល :**

✸ត្រូវស្គាល់អំពើបាបកម្រិតធ្ងន់ថា វាបំផ្លាញអំពើល្អដូចជាភ្លើងឆាបឆេះអុសអ៊ីចឹងដែរ។ ដូចដែលមានរីវ៉ាយ៉ាត់ក្នុងហាទីស។✸អ្វីដែលអល់ឡោះប្រទានឱ្យអ្នកដទៃគឺជាការកំណត់ និងគតិបណ្ឌិតរបស់ទ្រង់។ការមិនពេញចិត្តគឺបញ្ជាក់ថាប្រឆាំងនឹងអល់ឡោះ ហើយបញ្ជាក់ពីភាពកម្សោយនៃជំនឿរបស់គេចំពោះព្រះលិខិតរបស់ទ្រង់។ ✸ពាក្យដែលអ្នកពោលថា «ما شاء الله» «بارك الله لك» នៅពេលដែលអ្នកបានឃើញអ្វីដែលធ្វើឱ្យអ្នកចាប់ចិត្ត។ នេះជាភស្តុតាងថា ចិត្តរបស់អ្នកល្អប្រពៃ។✸ដឹងពីផលបុណ្យនៃការបោះបង់វា : នរណាដេកលក់ហើយក្នុងចិត្តរបស់គេគ្មានការឈ្នានីសចំពោះនរណាម្នាក់នោះ ផលបុណ្យរបស់គេធំធេងណាស់។ ដូចដែលមានរីវ៉ាយ៉ាត់ថា ណាពីបានប្រាប់ដំណឹងល្អបានចូលឋានសួគ៌ដល់សហាហ្បាត់ម្នាក់។ អាប់ឌុលឡោះពិនអាំរូបានដេកនៅផ្ទះគាត់។ អាប់ឌុលឡោះបានដឹងថាមកពីការគ្មានចិត្តឈ្នានីសទើបគាត់បានចូលឋានសួគ៌។





# ការបួងសួងសុំ

**គ្រប់សត្វលោកទាំងអស់ត្រូវការអល់ឡោះ ត្រូវការចំពោះអ្វីដែលទ្រង់មាន។ តែទ្រង់មិនត្រូវការពួកគេ ហើយក៏មិនចាំបាច់មានពួកគេដែរ។**
ពិតណាស់ អល់ឡោះបានដាក់កាតព្វកិច្ចឱ្យខ្ញុំបម្រើរបស់ទ្រង់សុំទូអា ដោយទ្រង់បានមានព្រះបន្ទូលថា :
﴿ ادْعُونِي أَسْتَجِبْ لَكُمْ إِنَّ الَّذِينَ يَسْتَكْبِرُونَ عَنْ عِبَادَتِي سَيَدْخُلُونَ جَهَنَّمَ دَاخِرِينَ ﴾មានន័យថា: «**ចូរពួកអ្នកបួងសួងសុំចុះចំពោះយើង យើងនឹងទទួលយកការបួងសួងសុំរបស់ពួកអ្នក។ ពិតណាស់ ពួកអ្នកដែលក្រអឺតក្រទមមិនព្រមគោរពសក្ការៈចំពោះយើង គឺ ពួកគេនឹងចុះនរកចាហាន់ណាំយ៉ាងអាម៉ាស់ជាទីបំផុត**»។(ហ្គហ្វៀរ : ៦០)
បានសេចក្តីថា មិនព្រមបួងសួងសុំមកចំពោះយើង។
ណាពីម៉ូហាំម៉ាត់បានមានប្រសាសន៍ថា: មានន័យថា: «**នរណាមិនបួងសួងសុំអល់ឡោះ គឺអល់ឡោះទ្រង់នឹងក្រោធខឹងចំពោះគេ**»។ (អ៊ីបនូម៉ាយ៉ះ)
ទន្ទឹមនឹងនេះ អល់ឡោះទ្រង់សព្វព្រះទ័យចំពោះការបួងសួងរបស់ខ្ញុំបម្រើទ្រង់ចំពោះទ្រង់។ ទ្រង់សព្វព្រះទ័យចំពោះអ្នកដែលទទូចសុំ និងបញ្ជិតខ្លួនចំពោះទ្រង់។ សហាហ្គាត់របស់ណាពីមានអារម្មណ៍ដឹងបែបនេះ ហើយ ពួកគេម្នាក់ៗមិនដែលប្រមាទមើលស្រាលចំពោះការបួងសួងសុំពីអល់ឡោះសូម្បីបន្តិច។ ពួកគេមិនបានយកបញ្ហារបស់ពួកគេទៅត្អូញត្អែរប្រាប់មនុស្សដូចគ្នា។នេះដោយសារតែពួកគេរំពឹងជឿទុកចិត្តចំពោះទ្រង់ ជិតស្និទ្ធ ចំពោះទ្រង់ ហើយទ្រង់ក៏ជិតស្និទ្ធនឹងពួកគេដែរ។ អនុវត្តតាមព្រះបន្ទូលរបស់ទ្រង់ថា : ﴿وَإِذَا سَأَلَكَ عِبَادِي عَنِّي فَإِنِّي قَرِيبٌ﴾ មានន័យថា: «**នៅពេលណាខ្ញុំរបស់យើងសួរអ្នក(មូហាំម៉ាត់)អំពីយើង។ ពិតណាស់ យើងនៅជិតបំផុត**»។ (អាល់ហ្បាគ៉ោះ : ១៨៦)
ទូអាមានឋានៈធំធេងណាស់ចំពោះអល់ឡោះ។ វាគឺជាការប្រតិបត្តិដ៏ថ្លៃថ្លាចំពោះអល់ឡោះជាម្ចាស់។ ជួនកាលវាអាចកែប្រែវាសនា ហើយទូអារបស់អ្នកមូស្លីមគេទទួលយក។ គ្មានការសង្ស័យទេ បើសិនជាមូលហេតុដែលគេត្រូវទទួល និងគ្មានការរាំង ។ គេប្រទានឱ្យអ្នកដែលទូអាបួងសួងសុំនូវប្រការមួយក្នុងចំណោមប្រការទាំងឡាយ ដូចដែលមានរ៉ាយ៉ាត់មួយណាពីម៉ូហាំម៉ាត់បានមានប្រសាសន៍ថា: មានន័យថា: «**គ្មានអ្នកមូស្លីមណាម្នាក់ដែលបានបួងសួងសុំអ្វីមួយដែលគ្មានអំពើបាប និងមិនកាត់កាលសាច់ញាតិ។លើកលែងតែអល់ឡោះនឹងប្រទានឱ្យគេនូវប្រការមួយក្នុងចំណោមបីគឺ : ជួនកាលអល់ឡោះឆ្លើយតបនឹងទូអារបស់គេភ្លាមៗ។ ជួនកាលទ្រង់រក្សាទុកឱ្យគេនៅថ្ងៃអាឃីរ៉ាត់។ ជួនកាលទ្រង់ឱ្យគេរួចផុតពីអំពើអាក្រក់ប៉ុនការសុំទូអានោះ។ពួកគេបានសួរថា: ចុះបើពួកយើងសុំទូអា**




ច្រើន? គាត់បានឆ្លើយថា: អល់ឡោះក៏ប្រទានឱ្យច្រើនអ៊ីចឹងដែរ»។ (អះម៉ាត់)

ប្រភេទនៃទូអាមានពីរ : ១.ទូអាបែបគោរពសក្ការៈ ដូចជាសឡាតនិងបួស។ ២. ទូអាគឺជាការទទួចសុំ និងស្នើសុំ។

**ភាពល្អប្រសើរជាងគ្នានៃអំពើល្អ:**

តើការសូត្រអាល់គួរអានល្អជាង ឬហ្ស៊ីកៀរ ឬទូអានិងការទទួចសុំល្អជាង?

ការសូត្រអាល់គួរអានល្អប្រសើរជាងគេដាច់ខាត។ បន្ទាប់មកការហ្ស៊ីកៀរនិងសូត្រធម៌សរសើរចំពោះអល់ឡោះ។ បន្ទាប់មកទៀត ការទូអានិងការទទួចសុំ។ នេះគឺជាការនិយាយជាលក្ខណៈរួម។ ក៏ប៉ុន្តែ ជួនកាលការប្រតិបត្តិដែលមិនប្រសើរលើសគេ អាចល្អជាងរបស់ដែលការប្រតិបត្តិប្រសើរលើសគេ។ ដូចជាទូអានៅថ្ងៃអារ៉ហ្វះល្អជាងសូត្រអាល់គួរអាន។ ការយកចិត្តទុកដាក់ហ្ស៊ីកៀរក្រោយសឡាតហ្វារហ្ជូល្អជាងការសូត្រអាល់គួរអាន។

**មូលហេតុនៃការទទួលយកទូអា : មានមូលហេតុខាងក្រៅ និងខាងក្នុង :**

១.មូលហេតុខាងក្រៅ: ធ្វើអំពើកុសលដូចជាការបរិច្ចាគ យកទឹកវ៉ូហ្ចូក សឡាតបែរតម្រង់ទៅគិបឡាត់ លើកដៃទាំងពីរ សរសើរចំពោះទ្រង់នូវអ្វីដែលសក្តិសមចំពោះទ្រង់។ ប្រើឈ្មោះនិងលក្ខណៈសម្បត្តិរបស់ទ្រង់ដែលសមស្របនឹងអ្វីដែលគេសុំទូអានោះ។ បើសិនជាទូអាចង់បានចូលឋានសួគ៌គឺ ត្រូវអង្វរករដោយរំឭកពីក្តីប្រទាន និងក្តីមេត្តាករុណារបស់ទ្រង់។ តែបើសិនជាទូអាដាក់បណ្តាសារអ្នកបំពានជិះជាន់គេគឺពុំត្រូវប្រើព្រះនាមរបស់អល់ឡោះ «الرحمن» និង«الكريم»នោះទេ។ តែត្រូវប្រើព្រះនាម «الجبار» និង «القهار»។

អំពីមូលហេតុផ្សេងទៀតគឺ សឡាវ៉ាតចំពោះណាពីនៅខាងដើម ពាក់កណ្តាលនិងចុងបញ្ចប់។ ទទួលស្គាល់កំហុសរបស់ខ្លួន និងអរគុណអល់ឡោះចំពោះលាភសក្ការៈរបស់ទ្រង់។ ឆ្លៀតឱកាសណាដែលមានភស្តុតាងបញ្ជាក់ថាអាចគេនឹងទទួលឆ្លើយតប។ ពីព្រោះវាជាពេលវេលាដែលគេទទួលយក ហើយពេលទាំងនោះមានច្រើនដូចជា :

❖ មួយថ្ងៃមួយយប់: ពេលទៀបភ្លឺជាពេលដែលអល់ឡោះចុះមកកាន់មេឃលោកីយ៍។ ចន្លោះពេលអាហ្សាន និងអ៊ីកម៉ាត់។ ក្រោយពេលយកទឹកវ៉ូហ្ចូករួច។ ក្នុងស៊ូជោត មុននឹងឱ្យសាឡាមសឡាត។ ក្រោយពេលសឡាតទាំងប្រាំពេល។ នៅពេលសូត្រអាល់គួរអានចប់។ នៅពេលមាន់រងាវ។ នៅពេលកំពុងធ្វើដំណើរ។ ទូអាជនរងគ្រោះ។ ទូអាអ្នកដែលមានការចាំបាច់។ ទូអារបស់ឪពុកម្តាយឱ្យកូន។ ទូអារបស់អ្នកមូស្លីមឱ្យបងប្អូនរបស់គេនៅពេលមានទុក្ខលំបាក នៅពេលជួបសត្រូវសង្គ្រាមក្នុងសមរភូមិ។



❖ ក្នុងមួយសប្តាហ៍: នៅថ្ងៃជុំអាត់ ជាពិសេសនៅពេលថ្ងៃជិតលិចក្នុងថ្ងៃនេះ។
❖ ក្នុងមួយខែ: ខែរ៉ម៉ាឌន នៅពេលជិតស្រាយបួស និងនៅពេលហូបបាយបួស នៅយប់ឡៃឡាទុលកទើរ នៅថ្ងៃអារ៉ហ្វះ។
❖ នៅទីកន្លែងពិសិដ្ឋ ដូចនៅក្នុងម៉ាស្ជិតទូទៅ នៅកៈហ្ពះ ជាពិសេសនៅមុលតាស្សិម( ស្ថិតនៅរវាងទ្វាកាក់ហ្ពះនិងថ្មខ្មៅ ) នៅម៉ាកមអ៊ីបព្រហ៊ីម នៅលើភ្នំសហ្វា និងម៉ារ៉វះ នៅអារ៉ហ្វះ នៅមុសដាលីហ្វះ នៅមីណា នៅក្នុងថ្ងៃធ្វើហាជ្ជ។ល។

**២.មូលហេតុខាងក្នុង:** សារភាពកំហុសដោយចិត្តស្មោះត្រង់ ត្រូវសងម្ចាស់គេវិញនូវអ្វីដែលខ្លួនបានរឹបអូសយកពីគេដោយអយុត្តិធម៌។ ស្វែងរកចំណីអាហារ សម្លៀកបំពាក់ និងលំនៅដ្ឋានស្អាតស្អំ។ ត្រូវរកស៊ីដែលហាឡាល់ បង្កើនការប្រតិបត្តិឱ្យបានច្រើន។ ជៀសវាងប្រការដែលគេបានហាមឃាត់។ ជៀសឆ្ងាយអំពីប្រការសង្ស័យ និងចំណង់តណ្ហា។ ត្រូវតាំងចិត្តជាប់ជាមួយនឹងទូអា។ មានទំនុកចិត្តចំពោះអល់ឡោះ ត្រូវសង្ឃឹមយ៉ាងមុតមាំ សុំជ្រកកោណនឹងអល់ឡោះ អង្វរករចំពោះទ្រង់ ទទូចសុំហើយសុំទៀត ប្រគល់កិច្ចការនោះជូនទ្រង់ មិនត្រូវសម្លឹងមើលអ្នកផ្សេងក្រៅពីទ្រង់។

**ប្រការដែលធ្វើឱ្យគេមិនទទួលយកទូអា :** ជួនកាលមនុស្សខ្លះបួងសួងសុំដែរ តែគេមិនទទួល ឬពន្យារការទទួល ហើយមូលហេតុរបស់វាមានច្រើនដូចជា: ទូអាសុំអ្នកដទៃរួមជាមួយនឹងអល់ឡោះ។ រៀបរាប់វែងឆ្ងាយក្នុងការទូអា ដូចជាសុំបញ្ចៀសពីភ្លើងនរក ភាពចង្អៀតរបស់វា ភាពងងឹតរបស់វា។ ដោយគ្រាន់តែសុំបញ្ចៀសពីភ្លើងនរកតែមួយម៉ាត់គឺគ្រប់គ្រាន់ ពុំចាំបាច់ទូអាវែងឆ្ងាយនោះទេ។ អ្នកមូស្លីមទូអាដាក់ផ្តាសាលើខ្លួនឯង ឬអ្នកដទៃដោយអយុត្តិធម៌។ ទូអាដោយខ្លួននៅតែប្រព្រឹត្តអំពើបាប និងកាត់កាល់សាច់ញាតិ ការទូអាដោយដាក់លក្ខខណ្ឌថា : « ឱអល់ឡោះជាម្ចាស់សូមទ្រង់អភ័យទោសឱ្យខ្ញុំផងបើទ្រង់ចង់»។ល។

តក់ក្រហល់ចង់ទទួលបានការឆ្លើយតប ដោយពាក្យថា ខ្ញុំបានបួងសួងសុំតែគេមិនឆ្លើយតបនឹងខ្ញុំសោះ។ នឿយណាយធុញទ្រាន់នឹងការទូអា។ ទូអាដោយចិត្តមិននឹងនរ មិនចាប់អារម្មណ៍នឹងការទូអា។ ខ្វះសុជីវធម៌នៅចំពោះអល់ឡោះ។

មានន័យថា: «**ប្រាកដណាស់ ណាពីបានឮបុរសម្នាក់ទូអានៅក្នុងសឡាតរបស់គេ** ហើយគេមិនបានសឡាវ៉ាតចំពោះណាពី។ ណាពីបានមានប្រសាសន៍ថា: «**ម្នាក់នេះតក់ក្រហល់ណាស់**»។ បន្ទាប់មកណាពីបានហៅគេ ហើយបាននិយាយទៅកាន់គេ ឬអ្នកដទៃថា **(បើនរណាម្នាក់ក្នុងចំណោមពួកអ្នកទូអា ចូរឱ្យគេចាប់ផ្តើដោយការសរសើរទៅចំពោះអល់ឡោះ បន្ទាប់មកសឡាវ៉ាតចំពោះណាពី បន្ទាប់មកទៀតចូរឱ្យគេបួងសួងតាមអ្វីដែលគេប្រាថ្នាចង់បាន**»។ (អាត់តៀរមីហ្ស៊ី) ទូអាសុំអ្វីដែលមិនអាច




កើតមានឡើងដូចជាទូអាសុំចង់រស់នៅអមតៈក្នុងលោកីយ៍។ ដូចគ្នាផងដែរការទូអាសុំដោយប្រើពាក្យចំណាប់ចុងចួនជ្រុលហួសពេក។ អល់ឡោះបានមានព្រះបន្ទូលថា : ﴿ ادْعُوا رَبَّكُمْ تَضَرُّعًا وَخُفْيَةً إِنَّهُ لَا يُحِبُّ الْمُعْتَدِينَ ﴾ មានន័យថា: «ឱពួកអ្នក(មានជំនឿ) ចូរបួងសួងសុំម្ចាស់របស់ពួកអ្នកដោយឱនលំទោននិងកោតខ្លាច។ ពិតណាស់ទ្រង់មិនសព្វព្រះទ័យចំពោះពួកអ្នកដែលបំពាននោះឡើយ»។(អាល់អាក់រ៉ហ្វ : ៥៥)

មានន័យថា : «អ៊ិបនូ អាប់ហ្គើសបាននិយាយថា ចូរពិនិត្យមើលចំណាប់ចុងចួននៃទូអារួចហើយចូរជៀសវាងពីវា។ ជាការពិតណាស់ខ្ញុំធ្លាប់ឃើញរ៉សូលុលឡោះ និងសហាហ្ពាត់របស់លោក មិនដែលធ្វើអ្វីផ្សេងក្រៅពីនេះ មានន័យថាពួកគាត់មិនដែលប្រព្រឹត្តក្រៅពីការជៀសវាងនោះទេ»។ (អាល់ពូខរី)

ជាមួយនោះដែរទូអាឮសំឡេងខ្លាំងជ្រុលហួស។ អល់ឡោះបានមានព្រះបន្ទូលថា : ﴿ وَلَا تَجْهَرْ بِصَلَاتِكَ وَلَا تُخَافِتْ بِهَا وَابْتَغِ بَيْنَ ذَٰلِكَ سَبِيلًا ﴾ មានន័យថា : «ចូរកុំសូត្រឮខ្លាំងៗក្នុងការប្រតិបត្តិសឡាត ហើយក៏មិនត្រូវសូត្រខ្សឹបឮតិចពេកដែរ ប៉ុន្តែអ្នកត្រូវជ្រើសរើសយកអ្វីដែលជាមធ្យម» ។អាអ៊ីហ្សះបាននិយាយថា «អាយ៉ាត់នេះបញ្ចុះមកទាក់ទងនឹងរឿងទូអា»។(អាល់អ៊ីសរ៉ក : ១១០)

សូណាត់សម្រាប់អ្នកដែលទូអាត្រូវរៀបចំទូអារបស់គេដូចតទៅ :

១.សរសើរចំពោះអល់ឡោះ។ ២.សឡាវ៉ាតទៅលើណាពី។ ៣.សារភាព និងទទួលស្គាល់កំហុសរបស់ខ្លួន។ ៤.អរគុណអល់ឡោះចំពោះលាភសក្ការៈរបស់ទ្រង់។ ៥.ចាប់ផ្ដើមទូអានិងផ្ដោតសំខាន់ទៅទូអាខ្លីហើយខ្លឹមដែលមានរីវ៉ាយ៉ាត់អំពីណាពីឬបុព្វបុរសឥស្លាមជំនាន់ដើម។ ៦.បញ្ចប់ទូអាដោយសឡាវ៉ាតទៅលើណាពី។

## នេះជាទូអាសំខាន់ៗចាំបាច់ត្រូវទន្ទេញវា :

| ពេលវេលាដែលត្រូវទូអា | ទូអាដែលណាពីគាត់បានសូត្រ : |
|---|---|
| ទូអាមុន និងក្រោយដេក | |
| باسمِك اللهُمَّ أَمُوتُ وَ أَحيَا | (ពិសមីកល់ឡោះហុំម៉ាអាមូតូវ៉ាអះយ៉ា) មុនគេង។មានន័យថា៖ឱអល់ឡោះជាម្ចាស់របស់ខ្ញុំ! ខ្ញុំសូមប្រសិទ្ធិពរជ័យដោយព្រះនាមរបស់ទ្រង់ក្នុងការស្លាប់ និងការរស់របស់ខ្ញុំ។ |
| "اَلحَمْدُ لِلّٰهِ الَّذِي أَحْيَانَا بَعْدَمَا أَمَاتَنَا وَإِلَيْهِ النُّشُوْرُ" | (អាល់ហាំទូលីលឡើហ៊ីលឡើហ្សីអះយ៉ាណាប៉ាក់ទើម៉ាអាម៉ាតាណាវ៉ាអ៊ីឡៃហ៊ីននូសួរ) សូត្រនៅពេលងើប។មានន័យថា៖ការសរសើរទាំងឡាយចំពោះអល់ឡោះជាម្ចាស់ដែលបានផ្តល់ឱ្យយើងនូវជីវិតរស់រានឡើងវិញក្រោយពីការដេកយកវា(ជីវិតនៅពេលដេកលក់)ពីយើង ហើយអ្វីៗនឹងវិលទៅរកទ្រង់វិញ។។ |





| ទូអាចំពោះការព្រឺខ្លាចនៅពេលដេក | |
|---|---|
| أَعُوذُ بِكَلِمَاتِ اللهِ التَّامَّاتِ، مِنْ غَضَبِهِ وَعِقَابِهِ، وشَرِّ عِبَادِهِ، وَمِنْ هَمَزَاتِ الشَّيَاطِين، وأَنْ يَحْضُرُون | (អាអ៊ូហ្សុពីកើលីម៉ាតីលឡើហ៊ីតតាមម៉ាតីមិនហ្កាហ្ឫពីហ វ៉ាមិនស្ចើររីអ៊ីពើទីហ វ៉ាមិនហើម៉ាហ្សើតីស្ចស្ចើយ៉ាតីន វ៉ាអែយ៉ះទូរ៉ូន) ។មានន័យថា៖ ខ្ញុំសុំពីអល់ឡោះតាមរយៈបន្ទូលដ៏មហាសុក្រិត សូមបញ្ចៀសរូបខ្ញុំអំពីការខឹងសំបា និងទារុណកម្មរបស់ទ្រង់។សូមទ្រង់បញ្ចៀសរូបខ្ញុំអំពីប្រការអាក្រក់នៃបណ្ដាខ្ញុំបំរើទាំងឡាយរបស់ទ្រង់ និងសូមទ្រង់បញ្ចៀសអំពីការញុះញង់របស់បណ្ដាស្ហៃតនទាំងឡាយ ហើយខ្ញុំសូមចំពោះទ្រង់កុំឱ្យពួកវាមករកខ្ញុំឱ្យសោះ។ |
| **នៅពេលដេកយល់សប្តិ** | |
| នៅពេលនរណាម្នាក់ដេកយល់សប្តិល្អ វាមកពីអល់ឡោះ គេត្រូវអរគុណចំពោះអល់ឡោះ ហើយនិយាយប្រាប់គេ។ បើសិនជាយល់សប្តិឃើញអាក្រក់ វាមកពីស្ហៃតូន គេត្រូវសុំបញ្ចៀសពីប្រការអាក្រក់នោះ ហើយពុំត្រូវនិយាយប្រាប់គេនោះទេ វាមិនធ្វើឱ្យគ្រោះថ្នាក់ដល់គេនោះឡើយ។ | |
| **សូត្រពេលចេញពីផ្ទះ** | |
| اللَّهُمَّ إِنِّي أَعُوذُ بِكَ أَنْ أَضِلَّ ، أَوْ أُضَلَّ، أَوْ أَزِلَّ، أَوْ أُزَلَّ ، أَوْ أَظْلِمَ ، أَوْ أُظْلَمَ ، أَوْ أَجْهَلَ ، أَوْ يُجْهَلَ عَلَيَّ | (អល់ឡោះហ៊ុំម៉ាអ៊ីនណីអាអ៊ូហ្សុពីកើអាន់អាទីលឡើ អៅអ៊ូទលឡើ អៅអាហ្សីលឡើ អៅអ៊ូហ្សាលឡើ អៅអាហ្សលីម អៅអ៊ូហ្សឡាំ អៅអាជហីល អៅយ៉ុជហើឡើអាឡៃយ៉ា)។មានន័យថា៖ ឱអល់ឡោះជាម្ចាស់!សូមទ្រង់បញ្ចៀសកុំឱ្យរូបខ្ញុំវង្វេង ឬត្រូវគេធ្វើឱ្យវង្វេង។ សូមកុំឱ្យរូបខ្ញុំជ្រុលច្រឡំលើផ្លូវខុស ឬត្រូវគេធ្វើឱ្យជ្រុលច្រឡំលើផ្លូវខុស។សូមកុំឱ្យរូបខ្ញុំធ្វើប្រការអយុត្តិធម៌ ឬត្រូវគេធ្វើប្រការអយុត្តិធម៌ និងសូមកុំឱ្យរូបខ្ញុំប្រព្រឹត្តអំពើល្ងង់ខ្លៅ ឬត្រូវគេធ្វើប្រការល្ងង់ខ្លៅមកលើឱ្យសោះ។ |
| بِسْمِ اللهِ، تَوَكَّلْتُ عَلَى اللهِ، وَلاَ حَوْلَ وَلا قُوَّةَ إِلاَّ بِاللهِ | (ពិសមីលឡើហ៊ីតាវ៉ាក់កិលតូអាលុលឡើហ៊ីឡើហៅឡើវ៉ាឡើគូវ៉ាតាអ៊ីលឡើពិលឡើហ)។ មានន័យថា៖ ដោយនាមរបស់អល់ឡោះរូបខ្ញុំសូមប្រគល់ខ្លួនចំពោះទ្រង់។គ្មានអំណាចឬឥទ្ធិពលអ្វីឡើយ គឺមានតែអល់ឡោះ។ |
| **ទូអាឱ្យអ្នករៀបការថ្មី** | |
| بَارَكَ اللهُ لَكَ، وبَارَكَ عَلَيْكَ، وجَمَعَ بَيْنَكُمَا فِي خَيْرٍ | (ពើរ៉កុលឡោះហ្សឡើកើ វ៉ាពើរ៉កើអាឡៃកើ វ៉ាជើម៉ាអាពៃណាគូម៉ាហ៊្វីលខុយរ៍)។ មានន័យថា៖ សូមអល់ឡោះប្រទានពរជ័យដល់អ្នក និងសម្រាប់អ្នក ព្រមទាំងសូមទ្រង់ប្រទាននូវការរស់នៅរបស់អ្នកទាំងពីរជួបប្រទះនូវប្រការល្អៗ។ |
| **អ្នកដែលឮមាន់រងាវ ឬកញ្ចៀវសត្វលា...** | |





**ហើយនៅពេលពួកអ្នកឮមាន់រងាវចូរពួកអ្នកសូត្រថា៖**«أَسْأَلُ الله مِنْ فَضْلِهِ» **(អាស់អាលុលឡោះហើមិនហ្វទលីហ)** ។មានន័យថា៖ខ្ញុំសុំពីអល់ឡោះដោយភាពថ្លៃថ្នូររបស់ទ្រង់។ពីព្រោះវាឃើញទេវតា(ملائكة)។

**នៅពេលពួកអ្នកឮសំរែកសត្វលា ត្រូវសូត្រថា៖** «أَعُوذُ بِاللهِ مِنَ الشَّيْطَانِ» **(អាអូហ្សូពិលឡើហ៊ីមីណាស់ស្ហៃតន)** ។មានន័យថា៖ខ្ញុំសុំពីអល់ឡោះបញ្ចៀសពីស្ហៃតន។ ពីព្រោះវាឃើញស្ហៃតន។

នៅពេលពួកអ្នកឮសម្លេងឆ្កែលូនិងសំរែកសត្វលានៅពេលយប់ ចូរពួកអ្នកសូត្រថា៖ «أَعُوذُ بِاللهِ» **(អាអូហ្សូពិលឡើហ៍)**

មានន័យថាៈខ្ញុំសុំបញ្ចៀសពីអល់ឡោះនូវប្រការអាក្រក់ទាំងឡាយ។

## មនុស្សដែលនិយាយទៅកាន់អ្នកថាខ្ញុំស្រលាញ់អ្នកក្នុងនាមអល់ឡោះ

អំពីអាណើសបាននិយាយថា មានបុរសម្នាក់នៅជាមួយណាពី ហើយស្របពេលនោះ មានបុរសម្នាក់ដើរកាត់។ គេនិយាយថា បពិត្រអ្នកនាំសាររបស់អល់ឡោះ ខ្ញុំស្រលាញ់បុរសម្នាក់នេះ។ ណាពីបានសួរថា «អ្នកនិយាយទៅកាន់វាហើយឬនៅ?» បុរសនោះឆ្លើយថា នៅទេ។ ណាពីបានមានប្រសាសន៍បន្តថា : «ចូរប្រាប់គេទៅ»។ គេបានទៅតាមបុរសនោះ ហើយប្រាប់ថា : «ខ្ញុំស្រលាញ់អ្នកក្នុងនាមអល់ឡោះ។ បុរសនោះតបវិញថា : អល់ឡោះស្រលាញ់អ្នកដូចដែលអ្នកស្រលាញ់បងប្អូនរបស់អ្នកដើម្បីទ្រង់ដែរ។

## នៅពេលបងប្អូនអ្នក មូស្លីមកណ្តាស់

នៅពេលនរណាម្នាក់កណ្តាស់ គេត្រូវសូត្រថា (الحَمْدُ لِلَّهِ) **(អាល់ហាំទូលិលឡើហ៍)** ។មានន័យថា៖ការសរសើរទាំងឡាយគឺសម្រាប់អល់ឡោះ។ បងប្អូនរបស់គេត្រូវឆ្លើយតបទៅគេវិញថា (يَرْحَمُكَ الله) **(យ៉ារហាមូកល់ឡោះ)** ។មានន័យថា៖សូមអល់ឡោះអាណិតស្រលាញ់អ្នក។ គេតបទៅវិញថា (يَهْدِيْكُمُ الله وَيُصْلِحُ بَالَكُمْ) **(យ៉ះទីគូមុលឡោះហ្វ៉ាយ៉ូសលីហ្វូពើឡើគុំ)** ។មានន័យថា៖សូមអល់ឡោះចង្អុលបង្ហាញ និងកែលំអស្ថានភាពរបស់អ្នក។

នៅពេលអ្នកកាហ្វៀរកណ្តាស់ ហើយថា (الحمد لله) **(អាល់ហាំទូលិលឡើហ៍)** ។មានន័យថា៖ការសរសើរទាំងឡាយគឺសម្រាប់អល់ឡោះ។គេត្រូវឆ្លើយតបថា «يهديكم الله» **(យ៉ះទីគូមុលឡោះ)** ។មានន័យថា៖សូមអល់ឡោះចង្អុលបង្ហាញ។ ហើយមិនត្រូវពោលថា «يرحمك الله» **(យ៉ារហាមូកល់ឡោះ)**ទេ។មានន័យថា៖សូមអល់ឡោះអាណិតស្រលាញ់អ្នក។

## ទូអាពេលកើតទុក្ខ

| | |
|---|---|
| لا إِلَهَ إِلاَّ اللهُ العَظِيمُ الحَلِيمُ، لا إِلَهَ إِلاَّ اللهُ | **(ឡើអ៊ីឡើហើអ៊ីលលល់ឡោះហូលអាហ្សីមុលហាលីម ឡើអ៊ីឡើហើអ៊ីលលល់ឡោះហូរ៉ប់ពុលអោរស្ហីលអាហ្សីម ឡើអ៊ីឡើហើអ៊ីលល់ឡោះហូរ៉ប់ពុសសើម៉ាវ៉ាតី វ៉ារ៉ប់ពុលអោរស្ហីលកើរីម)**។មានន័យ |



| | |
|---|---|
| رَبُّ العَرْشِ العَظِيمُ، لا إِلَهَ إلا اللهُ رَبُّ السَّمَاوَاتِ، وَرَبُّ الأَرْضِ وَرَبُّ العَرْشِ الكَرِيمِ | ថា៖ គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែអល់ឡោះមួយគត់ដ៏មហាធំធេង និងមហាសណ្ដោសប្រណី។គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែអល់ឡោះមួយគត់ ទ្រង់ជាម្ចាស់អារ៉ស្សដ៏ធំធេង។គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែអល់ឡោះមួយគត់ ទ្រង់ជាម្ចាស់ផែនដីទាំងប្រាំពីរជាន់ និងជាម្ចាស់អារ៉ស្សដ៏មហាថ្កុំថ្កើង។ |
| اللهُ اللهُ رَبِّي لا أُشْرِكُ بِهِ شَيْئًا | (អល់ឡោះហូរ៉ប់ពី ឡើអុស្ហរីគូពីហីស្ហៃអា) ។មានន័យថា៖អល់ឡោះជាម្ចាស់របស់ខ្ញុំ ហើយខ្ញុំមិនធ្វើប្រការស្ហ៊ីរិជាមួយទ្រង់នឹងអ្វីម្យ៉ាងជាដាច់ខាត។ |
| يَا حَيُّ يَا قَيُّومُ بِرَحْمَتِكَ أَسْتَغِيثُ | (យ៉ាហៃយ៉ូ យ៉ាកុយយ៉ូម ពីរ៉ោះម៉ាតីកើ អាស់តាហ្គីស) ។មានន័យថា៖ឱអល់ឡោះជាម្ចាស់! ដែលមិនត្រូវការពឹងពាក់អ្វីសោះ។ ដោយក្ដីមេត្តារបស់ទ្រង់ រូបខ្ញុំសូមពីទ្រង់នូវជំនួយ។ |
| "سُبْحَانَ اللهِ العظيمِ" | (ស៊ុបហាណល់ឡោះហ៊ីលអាហ្ស៊ីម) ។មានន័យថា៖អល់ឡោះជាម្ចាស់ដ៏មហាស្អាតស្អំបំផុត។ |
| **ទូអាទៅលើសត្រូវ** | |
| اللَّهُمَّ مُنْزِلَ الكِتَابِ، ومُجْرِى السَّحَابِ سَرِيْعَ الحِسَابِ، اهْزِمِ الأَحْزَابَ، اللَّهُمَّ اهْزِمْهُمْ وزَلْزِلْهُمْ | (អល់ឡោះហ៊ុំម៉ាមុនហ្ស៊ីឡាល់គីតាប វ៉ាមុជរីយ៉ាសសើហាប់ សើរីអាល់ហ៊ីសាប់ អ៊ីះហ្ស៊ីមីលអះហ្សាប អល់ឡោះហ៊ុំម៉ះហ្ស៊ីមហ៊ុំ វ៉ាហ្សាលហ្ស៊ីលហ៊ុំ)។ មានន័យថា៖ឱអល់ឡោះជាម្ចាស់!ជាអ្នកបញ្ចុះគីតាប ឆាប់រហ័សក្នុងការជំនុំជំរះ សូមទ្រង់ធ្វើឱ្យក្រុមនោះចាញ់យើងខ្ញុំផងចុះ។ឱអល់ឡោះសូមឱ្យពួកគេចាញ់ចុះ បំផ្លាញ់ពួកគេចុះ និងសូមទ្រង់ធ្វើឱ្យមានការភ័យខ្លាចញាប់ញ័រដល់ពួកគេផងចុះ។ |

| **ទូអាពេលក្រោកពីគេងពេលយប់** |
|---|
| **បុគ្គលណាដែលបានដឹងខ្លួននៅពេលយប់ហើយសូត្រថា៖**<br>لا إِلَهَ إلا اللهُ وَحْدَهُ لا شَرِيكَ لَهُ، لَهُ المُلْكُ وَلَهُ الحَمْدُ وَهُوَ عَلَى كُلِّ شَيْءٍ قَدِيرٌ، الحَمْدُ لِلهِ وَسُبْحَانَ اللهِ وَلا إِلَهَ إلا اللهُ وَاللهُ أَكْبَرُ وَلا حَوْلَ وَلا قُوَّةَ إلا باللهِ<br>(ឡើអ៊ីឡើហើអ៊ីលលល់ឡោះហូវ៉ះទើហូឡើស្ហ៊ីរីកើឡះ ឡើហុលមុលគូវ៉ាឡើហុលហាំទូ វ៉ាហូវ៉ាអាឡើគុលលីស្ហៃអ៊ីនក៏ទៀរ អាល់ហាំទូឡិលឡើហ៍ វ៉ាស៊ុបហាណុលឡោះ វ៉ាឡើអ៊ីឡើហើអ៊ីលលល់ឡោះ វ៉ល់ឡោះហូអ៉ីកពើរ វ៉ាឡើហៅឡើវ៉ាឡើគូវ៉ាតាអ៊ីលឡើពិលឡើហ៍ )មានន័យថា៖គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែអល់ឡោះមួយគត់ គ្មានស្ហ៊ីរិកនឹងទ្រង់ឡើយ។ការគ្រប់គ្រង និងការសរសើរទាំងឡាយសម្រាប់អល់ឡោះ។អល់ឡោះជាម្ចាស់ខ្លាំងពូកែលើសអ្វីៗទាំងអស់។ ភាពស្អាតស្អំ និងការកោតសរសើរគឺសម្រាប់អល់ឡោះហើយគ្មានទេម្ចាស់ផ្សេង |





ដែលត្រូវគេគោរពដ៏ពិតនោះគឺមានតែអល់ឡោះ។អល់ឡោះដ៏មហាធំធេង ហើយគ្មានកំលាំង និងអំណាចអ្វីមួយដែលពូកែឡើយ គឺមានតែអល់ឡោះមួយគត់។ បន្ទាប់មកសូត្រ៖ اللَّهُمَّ اغْفِرْ لِي (អល់ឡោះហ៊ុំម៉ាគហ្វីរលី)មានន័យថា៖ ឱអល់ឡោះជាម្ចាស់!សូមទ្រង់អភ័យទោសដល់រូបខ្ញុំផងចុះ។ឬបួងសួងសុំ គេនឹងទទួលការបួងសួងរបស់គេ ហើយបើគេយកទឹកវូឌុ ហើយសឡាតគេនឹងទទួលសឡាតរបស់គេ។

## នៅពេលមានឧបសគ្គ និងការលំបាក

| | |
|---|---|
| اللَّهُمَّ لا سَهْلَ إلاَّ مَا جَعَلْتَهُ سَهْلاً، وأنْتَ تَجْعَلُ الحَزْنَ إذَا شِئْتَ سَهْلاً | (អល់ឡោះហ៊ុំម៉ាឡើសាស់ឡើអ៊ីលឡើម៉ាជើអាល់តាហូសាស់ឡើវ៉ាអាន់តាតាជអាលុលហ្សហ្សណាអ៊ីហ្សើស្ហិតាសាស់ឡើ) ។មានន័យថា៖ឱអល់ឡោះជាម្ចាស់!កិច្ចការមួយមិនអាចងាយស្រួលបានឡើយលើកលែងតែអ្វីដែលទ្រង់ចង់ឱ្យមានការងាយស្រួលប៉ុណ្ណោះ។ទ្រង់អាចធ្វើឱ្យការងារដែលស្មុគស្មាញលំបាកនោះទៅជាការងារងាយបានប្រសិនបើទ្រង់មានចេតនា។ |

## ទូអាសងបំណុល

| | |
|---|---|
| اللَّهُمَّ إنِّي أعُوذُ بكَ مِنَ الهَمِّ والحَزَنِ، والعَجْزِ والكَسَلِ، والبُخْلِ والجُبْنِ، وضَلعِ الدَّيْنِ وغَلَبَةِ الرِّجَالِ | (អល់ឡោះហ៊ុំម៉ាអ៊ីននីអាអ៊ូហ្សពីកើមិណាល់ហាំមី វ៉ាល់ហាហ្សានី វ៉ាល់អាជហ្សី វ៉ាល់កើសាល់ វ៉ាលប៊ុបណី វ៉ាល់ពុខឡី វ៉ាហ្សរឡើអ៊ីទទៃននី វ៉ាហ្គរឡើពើតីរ៉ុជើល ) ។មានន័យថា៖ឱអល់ឡោះជាម្ចាស់!ខ្ញុំសុំពីទ្រង់បញ្ចៀសរូបខ្ញុំពីទុក្ខកង្វល់ផ្សេងៗ ភាពទន់ខ្សោយ ភាពខ្ជិលច្រអូស ភាពកំសាក ភាពកំណាញ់ បំណុលច្រើនលើសលប់ និងការសង្កត់សង្កិនរបស់មនុស្ស។ |

## ទូអាចូលបង្គន់

ពេលចូលបង្គន់ "اَللَّهُمَّ إِنِّي أَعُوْذُ بِكَ مِنَ الْخُبُثِ وَالْخَبَائِثِ"(អល់ឡោះហ៊ុំម៉ាអ៊ីននីអាអ៊ូហ្សពីកើមិណាល់ខូពូស៊ីវ៉ាល់ខពើអ៊ីស)។មានន័យថា៖ឱអល់ឡោះជាម្ចាស់! ខ្ញុំសុំពីទ្រង់បញ្ចៀសរូបខ្ញុំពីអំពើអាក្រក់នៃបណ្តាស្ទេតនប្រុស និងស្ទេតនស្រី។
ចេញពីបង្គន់វិញ "غُفْرَانَكَ" (ហ្គហ្វរ៉ាណាក)។មានន័យថា៖ខ្ញុំសូមពីទ្រង់ (អល់ឡោះ)នូវការសណ្តោសប្រណី។

## ចិត្តមិនស្ងប់ក្នុងសឡាត

នោះគឺស្ទេតនដែលមានឈ្មោះថាខន់ហ្សាប់ បើសិនជាអ្នកមានអារម្មណ៍ថា វាមករំខាន សូមសូត្រ (أَعُوْذُ بِاللهِ مِنَ الشَّيْطَانِ الرَّجِيْمِ) (អាអ៊ូហ្សពិលឡើហ៊ីមីណាស់ស្ទេតនណីររ៉ាយ៉ីម) មានន័យថា៖ខ្ញុំសុំពីអល់ឡោះបញ្ចៀសពីស្ទេតន។ពីព្រោះវាឃើញស្ទេតន។ ហើយស្តោះទឹកមាត់ទៅខាងឆ្វេងដៃចំនួនបីដង។

## នៅពេលស្ទ័ជោត



| | |
|---|---|
| اللَّهُمَّ اغْفِرْ لِي ذَنْبِي كُلَّهُ، دِقَّهُ وجِلَّهُ، وَأَوَّلَهُ وآخِرَهُ، وعَلانِيَتَهُ وَسِرَّهُ | (អល់ឡោះហុំម៉ោគហ្វីរលីហ្សាន់ពី គុលឡើហូ ទីកក៏ហូ វ៉ាជីលឡើហូ វ៉ាអៅវ៉ាឡើហូ វ៉ាអាខីរ៉ហូ វ៉ាអាឡើណីយ៉ាតាហូ វ៉ាសៀរ៉ហូ)មានន័យថា៖ឱអល់ឡោះជាម្ចាស់! សូមទ្រង់អភ័យទោសទាំងឡាយដល់រូបខ្ញុំផង ទោសតូចក្តី ធំក្តី ទោសកន្លងមកក្តី ទោសពេលខាងមុខក្តី ទោសជាលក្ខណៈចំហក្តី និងជាលក្ខណៈអាថ៌កំបាំងក្តី។ |
| سُبْحَانَكَ اللَّهُمَّ رَبَّنَا وَ بِحَمْدِكَ، اللَّهُمَّ اغْفِرْ لِي | (ស៊ុបហាណាកើរប៉ពី វ៉ាពីហាំទីកើ អល់ឡោះហុំម៉ោគហ្វីរលី) មានន័យថា៖ឱម្ចាស់ដ៏មហាស្អាត់ស្អំរបស់យើងខ្ញុំ និងការកោតសរសើរចំពោះទ្រង់។ឱអល់ឡោះសូមអធ្យាស្រ័យដល់រូបខ្ញុំផងចុះ |
| اللَّهُمَّ إِنِّي أَعُوذُ بِرِضَاكَ مِنْ سَخَطِكَ، وَبِمُعَافَاتِكَ مِنْ عُقُوبَتِكَ، وأَعُوذُ بِكَ مِنْكَ، لا أُحْصِي ثَنَاءً عَلَيْكَ، أَنْتَ كَمَا أَثْنَيْتَ عَلَى نَفْسِكَ | (អល់ឡោះហុំម៉ាអ៊ីនណីអាអូហ្សពីរីហ្ឋរកើមិនសើខតីកើ វ៉ាពីមូអាហ្វាតីកើមិនអូគូពើតីកើ វ៉ាអាអូហ្សពីកើ ឡើអូសស៊ីសាណាកអាឡៃកើ អាន់តាកើម៉ាអាស់ណៃតាអាឡើណាហ្វស៊ីកើ) មានន័យថា៖ ឱអល់ឡោះជាម្ចាស់! ខ្ញុំសូមពីទ្រង់ដោយក្តីមេត្តារបស់ទ្រង់ សូមបញ្ចៀសរូបខ្ញុំពីកំហឹងរបស់ទ្រង់ផងចុះ។ ដោយការអនុគ្រោះរបស់ទ្រង់ ខ្ញុំសូមជៀសពីទណ្ឌកម្មរបស់ទ្រង់ផង ហើយរូបខ្ញុំសូមពីទ្រង់នឹងចំពោះទ្រង់ សូមបញ្ចៀសរូបខ្ញុំផង។ រូបខ្ញុំពុំអាចគិតឃើញអស់ចំពោះការសរសើរ ចំពោះទ្រង់ដូចដែលទ្រង់បានសរសើរលើខ្លួនទ្រង់នោះឡើយ។ |
| **ទូអាស៊ូជោតទីឡាវ៉ះ** | |
| اللَّهُمَّ لَكَ سَجَدْتُ ، وَبِكَ آمَنْتُ ، وَلَكَ أَسْلَمْتُ، سَجَدَ وَجْهِي لِلَّذِي خَلَقَهُ، وَصَوَّرَهُ، وَشَقَّ سَمْعَهُ وبَصَرَهُ، تَبَارَكَ اللهُ أَحْسَنُ الخَالِقِينَ | (អល់ឡោះហុំម៉ាឡើកើសើជាទតូ វ៉ាពីកើអាម៉ាន់តូ វ៉ាឡើកើអាស់ឡាំតូ សើជើទើវ៉ាជហ៊ីយ៉ាលីលឡើហ្សីខឡើក៏ហូ វ៉ាសៅវ៉ារ៉ហូ វ៉ាស្កកក៏សាំអាហូ វ៉ាពើសរ៉ហូ តាពើរ៉កល់ឡោះហូអះសានុលខលីកីន) មានន័យថា៖ ឱអល់ឡោះជាម្ចាស់! ចំពោះទ្រង់ហើយដែលខ្ញុំស៊ូជោទ ហើយនឹងទ្រង់ហើយដែលខ្ញុំមានជំនឿ ហើយចំពោះទ្រង់ផងដែរដែលខ្ញុំជាអ្នកមូស្លីម មុខរបស់ខ្ញុំសូមក្រាបចំពោះទ្រង់(អល់ឡោះ)ដែលបានបង្កើតវា បានតុបតែងវា បានធ្វើឱ្យឮ និងធ្វើឱ្យឃើញដោយអំណាចនិងឥទ្ធិពលរបស់អល់ឡោះ។ ការប្រសិទ្ធិបរចំពោះអល់ឡោះជាម្ចាស់ជាអ្នកបង្កើតដ៏ល្អឥតខ្ចោះ(គ្មានគូរប្រដូច)។ |
| **ទូអានៅពេលចាប់ផ្តើមសឡាត** | |
| اللَّهُمَّ بَاعِدْ بَيْنِي وبَيْنَ خَطَايَايَ كَمَا بَاعَدْتَ بَيْنَ المَشْرِق | (អល់ឡោះហុំម៉ាពើអ៊ីទហ្លៃនីវ៉ាហ្លៃណាខតយ៉ាយ៉ា កើម៉ាពើអ៊ីទតាហ្លៃណាល់ម៉ាស្ករីកីវ៉ាល់ម៉ោគរិប អល់ឡោះហុំម៉ាណុកគីណីមិនខតយ៉ាយ៉ា កើម៉ាយ៉ូណកកស់សៅពុលអាប់យ៉ាទូមីណាទទើ |





| | |
|---|---|
| والمَغْرب، اللَّهُمَّ نَقِّنى مِنْ خَطَايَاىَ، كَمَا يُنَقَّى الثَّوْبُ الأَبْيَضُ مِنَ الدَّنَسِ، اللَّهُمَّ اغْسِلْنى مِنْ خَطَايَاىَ، بالثَّلْجِ والمَاءِ والبَرَدِ | ណាស អល់ឡោះហុំម៉ោគស៊ីលណីពិលម៉ាអ៊ី វ៉ាសសាល់ជី វ៉ាលពើរ៉ទី ) មានន័យថា៖ឱអល់ឡោះជាម្ចាស់! សូមទ្រង់ធ្វើឱ្យឃ្លាតឆ្ងាយផងចុះរវាងរូបខ្ញុំ និងបណ្តាកំហុសរបស់ខ្ញុំដូចដែលអល់ឡោះបានធ្វើឱ្យឃ្លាតពីគ្នារវាងទិសខាងកើត និងខាងលិច។ ឱអល់ឡោះជាម្ចាស់!សូមសម្អាត់រូបខ្ញុំពីបណ្តាទោសកំហុសរបស់ខ្ញុំផងចុះ ដូចដែលទ្រង់បានសម្អាត់សំលៀកបំពាក់ដ៏សស្អាតពីភាពកខ្វក់។ឱអល់ឡោះជាម្ចាស់!សូមទ្រង់លាងបណ្តាកំហុសរបស់ខ្ញុំ ដោយទឹក ទឹកកក និងព្រិលផងចុះ។ |

## ទូអាចុងក្រោយបង្អស់នៃសឡាត

| | |
|---|---|
| اللَّهُمَّ إِنِّى ظَلَمْتُ نَفْسِى ظُلْماً كَثِيراً، وَلَا يَغْفِرُ الذُّنُوبَ إِلاَّ أَنْتَ، فاغْفِرْ لِى مَغْفِرَةً مِنْ عِنْدِكَ، وارْحَمْنى إِنَّك أَنْتَ الغَفُورُ الرَّحِيمُ | (អល់ឡោះហុំម៉ាអ៊ីនណីហ្សរឡាំតួណហ្វស៊ីហ្សុលម៉ាន់កើស៊ីរ៉ វ៉ាឡៃយ៉ោគហ្វីរ៉ហ្សហ្សណ្វបពើអ៊ីលឡើអាន់តា ហ្វោគហ្វីរលី ម៉ោគហ្វីរ៉តាន់មិនអ៊ីនទិកើ វ៉ារហាំណីអ៊ីនណាកើអាន់តាលហ្គហ្វូរ៉ររ៉ហ៊ីម ) មានន័យថា៖ឱអល់ឡោះជាម្ចាស់! រូបខ្ញុំគឺជាអ្នកដែលធ្វើខុសចំពោះខ្លួនឯងច្រើនណាស់ គ្មាននរណាម្នាក់ដែលអាចលើកលែងទោសកំហុសនេះបានទេ មានតែទ្រង់មួយបុណ្ណោះ។ សូមទ្រង់លើកលែងទោសកំហុសឱ្យរូបខ្ញុំផងហើយសូមអាណិត អាសូដល់រូបខ្ញុំផង។ ទ្រង់គឺពោពេញដោយការអធ្យាស្រ័យ និងពោពេញទៅដោយការអាណិតស្រលាញ់។ |

## បន្ទាប់ពីសឡាត

| | |
|---|---|
| اللهُمَّ أَعِنِّى عَلى ذِكْرِكَ وَشُكْرِكَ وَحُسْنِ عِبَادَتِكَ | (អល់ឡោះហុំម៉ាអាអ៊ីនណីអាឡើហ្សិគរីកើវ៉ាស្ហុករីកើវ៉ាហ្វុសណីអ៊ីពើទើតិក ) មានន័យថា៖ឱអល់ឡោះជាម្ចាស់! សូមទ្រង់ជួយជុំរុញរូបខ្ញុំឱ្យនឹកឃើញដល់ទ្រង់ជានិច្ចផង។ សូមទ្រង់ធ្វើឱ្យរូបខ្ញុំចេះថ្លែងអំណរគុណចំពោះទ្រង់ និងជួយឱ្យរូបខ្ញុំធ្វើនូវអំពើដែលល្អៗផងចុះ។ |
| اللَّهُمَّ إِنّى أعُوذُ بكَ مِنَ الكُفرِ و الفقرِ و عَذابِ القَبرِ | (អល់ឡោះហុំម៉ាអ៊ីនណីអាអ៊ូហ្សពីកើមិណាល់គុហ្វរី វ៉ាល់ហ្វកវីវ៉ាអាហ្សើពីលកប់រី) មានន័យថា៖ឱអល់ឡោះជាម្ចាស់! ខ្ញុំសុំពីទ្រង់ឱ្យបញ្ចៀសរូបខ្ញុំពីភាពស្ទីរិក ភាពក្រីក្រ និងទណ្ឌកម្មនៅក្នុងផ្នូរផងចុះ។ |

## ទូអាជូនអ្នកធ្វើល្អ

នរណាគេធ្វើអំពើល្អចំពោះខ្លួន នោះត្រូវទូអាជូនគេថា៖ (جَزَاكَ اللهُ خَيْرًا) (ជើហ្សើកល់ឡោះហ្វខុយរ៉ ) មានន័យថា៖សូមអល់ឡោះផ្តល់នូវកុសលដ៏ប្រពៃដល់អ្នក។ នេះជាការអរគុណដ៏ប្រសើរបំផុត ហើយអ្នកដែលធ្វើល្អតបវិញថា៖ «وَجَزَاكَ» (វ៉ាជើហ្សើកើ )ឬ «وَإِيَّاكَ» (វ៉ាអ៊ីយ៉ាកើ ) មានន័យថា៖សូមឱ្យអល់ឡោះផ្តល់កុសលដ៏ប្រពៃដល់អ្នកផងដែរ។




| នៅពេលឃើញភ្លៀងធ្លាក់ | |
|---|---|
| اللَّهُمَّ صَيِّباً نَافِعاً | (អល់ឡោះហុំម៉ាស្វួយយីហ្កាន់ណាហ្វីអា) មានន័យថា៖ឱអល់ឡោះជាម្ចាស់! សូមទ្រង់ធ្វើឱ្យទឹកភ្លៀងមានផលប្រយោជន៍ផងចុះ។ |
| ពីរដងឬបីដង "مُطِرْنَا بِفَضْلِ اللهِ وَرَحْمَتِهِ" (មុ៉ូតៀរណាពីហ្វោទលីលឡើហ៊ីវ៉ារ៉ោះម៉ាតិះ) មានន័យថា៖យើងត្រូវបានគេផ្តល់ទឹកភ្លៀង ដែលប្រកបដោយភាពថ្កុំថ្កើង និងក្តីអាណិតស្រលាញ់របស់អល់ឡោះ។ | |
| **នៅពេលខ្យល់ព្យុះ** | |
| اللَّهُمَّ إِنِّي أَسْأَلُكَ خَيْرَهَا، وَخَيْرَ مَا فِيهَا، وَخَيْرَ مَا أُرْسِلَتْ بِهِ، وأعُوذُ بِكَ مِنْ شَرِّهَا، وَشَرِّ مَا فِيهَا، وَشَرِّ مَا أُرْسِلَتْ بِهِ | (អល់ឡោះហុំម៉ាអ៊ីននីអាស់អាលូកើខុយរ៉ហើ វ៉ាខុយរ៉ម៉ាហ្វីហើ វ៉ាខុយរ៉ម៉ាអូរស៊ីឡាត់ពីហ វ៉ាអាអ៊ូហ្សូពីកើមិនស្ហើររីហើ វ៉ាស្ហើររីម៉ាហ្វីហើ វ៉ាស្ហើររីម៉ាអ៊ូរស៊ីឡាត់ពិហ) មានន័យថា៖ឱអល់ឡោះជាម្ចាស់! ពិតណាស់ ខ្ញុំសូមពីទ្រង់នូវប្រការល្អ និងអ្វីដែលជាប្រការល្អ ព្រមទាំងប្រការល្អដែលវាត្រូវបានគេបញ្ជូនមក។ ខ្ញុំសូមឱ្យទ្រង់បញ្ចៀសឱ្យឆ្ងាយនូវប្រការអ្វីដែលជា ប្រការអាក្រក់ និងប្រការអាក្រក់ដែលត្រូវបានគេបញ្ជូនមកជាមួយវា។ |
| **នៅពេលឃើញកូនខែ** | |
| اللَّهُمَّ أَهِلَّهُ عَلَيْنَا بالأَمْنِ والإِيمَانِ، وَالسَّلامَةِ وَالإِسْلامِ، وَالتَّوْفِيْقِ لِمَا تُحِبُّ رَبَّنَا وَتَرْضَى، رَبُّنَا وَرَبُّكَ اللهُ | (អល់ឡោះហុំម៉ាអាហ៊ីលឡើហូអាឡៃណា ពិលយ៉ុំណី វ៉ាល់អ៊ីម៉ាណី វ៉ាសសាឡាម៉ាតី វ៉ាលអ៊ីសឡាមមុី ហ៊ីឡើលូខុយរីន វ៉ារ៉ុស្ហូទីន រ៉ប់ពីវ៉ារ៉ប្បូកល់ឡោះហ៍) មានន័យថា៖ឱអល់ឡោះជាម្ចាស់!សូមទ្រង់បញ្ចេញវា(ចំនិតដួងខែ)មកលើពួកយើង ដោយផ្តល់នូវសេចក្តីសុខ មានជំនឿ មានសុវត្ថិភាព មានភាពជាឥស្លាម ចំនិតដួងខែដែលល្អប្រសើរ និងការចង្អុលបង្ហាញ។អល់ឡោះជាម្ចាស់របស់យើងខ្ញុំ និងជាម្ចាស់របស់អ្នក។ |
| **អ្នកជូនដំណើរគេ** | |
| អ្នកជូនដំណើរត្រូវសូត្រថា៖ "أَسْتَوْدِعُ اللهَ دِيْنَكَ وَأَمَانَتَكَ وَخَوَاتِيْمَ عَمَلِكَ" (អាស់តៅទីអូលឡោះហើទីណាកើ វ៉ាអាម៉ាណាតាកើ វ៉ាខវ៉ាតីម៉ាអាម៉ាលីកើ) មានន័យថា៖ខ្ញុំសូមពីអល់ឡោះឱ្យថែរក្សាសាសនារបស់អ្នក ភាពស្មោះត្រង់របស់អ្នក និងទីបញ្ចប់នៃអំពើរបស់អ្នកឱ្យស្ថិតស្ថេរលើផ្លូវល្អ។<br>អ្នកធ្វើដំណើរត្រូវតបវិញថា៖ "أَسْتَوْدِعُكُمُ اللهَ الَّذِيْ لاَ تَضِيْعُ وَدَائِعُهُ" (អាស់តៅទីអ៊ូគូមុលឡោះហាល់ឡើហ្សីឡើតាទីអ៊ីវ៉ាទើអ៊ីអូហូ) មានន័យថា៖ខ្ញុំសូមពីអល់ឡោះឱ្យថែរក្សារូបអ្នកព្រោះទ្រង់ជាអ្នកថែរក្សាដ៏ល្អបំផុត។ | |
| **ទូអានៅពេលដែលឃើញអ្វីដែលស្រលាញ់និងអ្វីដែលស្អប់** | |
| នៅពេលដែលរ៉សូលុលឡោះឃើញអ្វីដែលលោកស្រលាញ់លោកមានប្រសាសន៍ | |




ថា៖ الحَمْدُ لله الَّذي بنِعْمَتِهِ تَتِمُّ الصَّالحاتُ
(អាល់ហាំទូលីលឡើហ៊ីលឡើហ្ស៊ីពីណែកម៉ាតីហ៊ីតាតីមមុស្វសលីហាត) មានន័យថា៖ការសរសើរទាំងឡាយគឺសម្រាប់អល់ឡោះ។ ដោយសារពរជ័យរបស់ទ្រង់ទើបកិច្ចការដ៏ប្រពៃត្រូវបានសំរេច។
ហើយនៅពេលដែលលោកឃើញអ្វីដែលលោកមិនពេញចិត្តលោកមានប្រសាសន៍ថា៖ الحَمْدُ لله على كلّ حال (អាល់ហាំទូលីលឡើហ៊ីអាឡើគុលលីហាល) មានន័យថា៖ការសរសើរទាំងឡាយគឺសម្រាប់អល់ឡោះ នៅគ្រប់កាលៈទេសៈទាំងអស់។

## ទូអារធ្វើដំណើរ

اللهُ أَكْبَرُ، اللهُ أَكْبَرُ، اللهُ أَكْبَرُ، {سُبْحَانَ الَّذِي سَخَّرَ لَنَا هَذَا وَمَا كُنَّا لَهُ مُقْرِنِينَ * وَإِنَّا إِلَى رَبِّنَا لَمُنْقَلِبُونَ}. اللَّهُمَّ إِنَّا نَسْأَلُكَ فِي سَفَرِنَا هَذَا البِرَّ والتَّقْوى، ومِنَ العَمَل مَا تَرْضَى، اللَّهُمَّ هَوِّنْ عَلَيْنَا سَفَرَنَا هَذَا وَاطْوِ عَنَّا بُعْدَهُ، اللَّهُمَّ أَنْتَ الصَّاحِبُ فِي السَّفَر، والخَلِيفَةُ فِي الأَهْل، اللَّهُمَّ إِنِّي أَعُوذُ بِكَ مِنْ وَعْثَاءِ السَّفَر، وَكَآبَةِ المَنْظَر، وسُوءِ المُنْقَلَبِ فِي المَالِ والأَهْل

(អល់ឡោះហូអឹកពើរ អល់ឡោះហូអឹកពើរ អល់ឡោះហូអឹកពើរៈ ស៊ុបហាណាល់ឡើហ្សីសខខរ៉ឡើណាហើហ្សើ វ៉ាម៉ាកុណណាឡើហូម៉ុករីណីន វ៉ាអ៊ីនណាអ៊ីឡើរ៉បពីណាឡើមុនក៏លីពូន អល់ឡោះហ៊ុំម៉ាអ៊ីនណាណាស់អាល្លូកើហ្វីសាហ្វារីណាហើហ្សាល់ហ្បៀរ៉ វ៉ាតតុកវ៉ា វ៉ាមីណាល់អាម៉ាលី ម៉ាតារហ្ទរ អល់ឡោះហ៊ុំម៉ាហៅវិនអាឡៃណាសាហ្វារីណាហើហ្សើ វ៉ាតវីអាន់ណាពួកទីហូ អល់ឡោះហ៊ុំម៉ាអាន់តាសរហ៊ីពហ៊ីសសាហ្វារី វ៉ាល់ខលីហ្វាតូ ហ៊ីលអះលី អល់ឡោះហ៊ុំម៉ាអ៊ីនណីអាអូហ្សុពីកើមិនវ៉ាអសាអ៊ីសសាហ្វារី វ៉ាកើអាពើតិ៍លម៉ាន់ហ្សរី វ៉ាសូអ៊ីលមុនក៏ឡើពីហ្វីលម៉ាលីវ៉ាលអះលី) មានន័យថា៖អល់ឡោះដ៏មហាធំធេង(បីដង) ទ្រង់ដ៏មហាបរិសុទ្ធដែលទ្រង់បានសំរួលដល់ពួកយើងខ្ញុំនូវករណីនេះ ហើយពុំមែនពួកយើងខ្ញុំជាអ្នកមានលទ្ធភាពក្នុងករណីនេះទេ។ ពិតណាស់ពួកយើងនឹងត្រូវវិលត្រឡប់ទៅកាន់ម្ចាស់របស់យើងវិញ។ឱអល់ឡោះជាម្ចាស់! ពិតណាស់ពួកយើងសូមបួងសួងចំពោះទ្រង់លើការធ្វើដំណើររបស់យើងខ្ញុំឱ្យស្ថិតក្នុងប្រការល្អ និងការកោតខ្លាចចំពោះទ្រង់ព្រមទាំងការប្រតិបត្តិនូវអ្វីដែលទ្រង់យល់ព្រម។ឱអល់ឡោះសូជួយសម្រួលដល់ការធ្វើដំណើររបស់យើងខ្ញុំនេះ ឱ្យបានងាយស្រួល និងសូមទ្រង់បង្រួមការឆ្ងាយនៃដំណើរនេះដល់យើងខ្ញុំផង។ឱអល់ឡោះ!ទ្រង់ជាអ្នកថែរក្សាយើងក្នុងការធ្វើដំណើរ និងជាអ្នកគ្រប់គ្រងលើគ្រួសារ។ឱអល់ឡោះ!ពិតណាស់ខ្ញុំសូមទ្រង់បញ្ចៀសរូបខ្ញុំឱ្យឆ្ងាយពីការលំបាកនៃការធ្វើដំណើរ ការនឿយហត់ និងការផ្លាស់ប្តូរស្ថានភាព ពីល្អទៅអាក្រក់ដែលកើតមានឡើងក្នុងគ្រួសារ និងទ្រព្យសម្បត្តិ។
នៅពេលត្រលប់មកវិញត្រូវសូត្របន្ថែមថា "آيِبُوْنَ تَائِبُوْنَ عَابِدُوْنَ لِرَبِّنَا حَامِدُوْنَ" (អាយ៉ីពូណាតាអ៊ីពូណាអាពីទូណាលីរ៉ប់ពីណាហាមីទូណា) មានន័យថា៖យើងខ្ញុំវិលត្រឡប់មកវិញក្នុងនាមជាអ្នកសារភាពនូវទោសកំហុស ជាអ្នកគោរពប្រតិបត្តិ និងជា



អ្នកកោតសរសើរទៅចំពោះម្ចាស់របស់ពួកយើង។

## ទូអានៅពេលចូលដេក

| | |
|---|---|
| اللَّهُمَّ أَسْلَمْتُ نَفْسِي إِلَيْكَ، وَفَوَّضْتُ أَمْرِي إِلَيْكَ، وَوَجَّهْتُ وَجْهِي إِلَيْكَ، وأَلْجَأْتُ ظَهْرِي إِلَيْكَ، رَغْبَةً ورَهْبَةً إِلَيْكَ، لاَ مَلْجَأَ وَلا مَنْجَا مِنْكَ إِلاَّ إِلَيْكَ، آمَنْتُ بِكِتَابِكَ الَّذِي أَنْزَلْتَ، وَبِنَبِيِّكَ الَّذِي أَرْسَلْتَ | **(អល់ឡោះហ៊ុំម៉ាអាសឡាំតួណាហ្វស៊ីអ៊ីឡៃកើ វ៉ាហ្វៅវ៉ាទតួអាំរី អ៊ីឡៃកើ វ៉ាអាល់យាក់តួហ្វេព្រះរីអ៊ីឡៃកើរ៉ោះពើតាន់ វ៉ារ៉ោគពើ តាន់អ៊ីឡៃកើ ឡើម៉ាលជើអា វ៉ាឡើម៉ាន់ជើមិនកើ អាម៉ាន់តួពីគី តាពីកាល់ឡើហ្សីអាន់ហ្សាល់តា វ៉ាណាពីយីកាល់ឡើហ្សីអារ សាលតា)** មានន័យថា៖ឱអល់ឡោះជាម្ចាស់!ខ្ញុំសូមប្រគល់ខ្លួន និងកិច្ចការទាំងឡាយរបស់ខ្ញុំទៅចំពោះទ្រង់។រូបខ្ញុំសូមប្រគល់ខ្លួនទៅចំពោះទ្រង់ ព្រមទាំងសុំជំនួយពីទ្រង់ដោយការចង់បាន និងការកោតខ្លាចចំពោះទ្រង់។ ពុំមានទីពឹង និងទីដែលមានសុវត្ថិភាពណាមួយឡើយគឺមានតែការសុំចំពោះទ្រង់។ខ្ញុំមានជំនឿចំពោះគម្ពីររបស់ទ្រង់ដែលទ្រង់បានបញ្ចុះមក និងមានជំនឿចំពោះរ៉ស៊ូល( ណាពីមូហាំម៉ាត់ )របស់ទ្រង់ដែលទ្រង់បានបញ្ជូនមក។ |
| الحَمْدُ للهِ الَّذِي أَطْعَمَنَا وسَقَانَا، وكَفَانَا، وآوَانا؛ فَكَمْ مِمَّنْ لا كَافِيَ لَهُ وَلا مُؤْوِيَ | **(អាល់ហាំទូលីលឡើហ៊ីលឡើហ្សីអោតអាម៉ាណា វ៉ាសើក៏ណា វ៉ាអាវ៉ាណា ហ្វាកាំមិមម៉ាន់ឡើកើហ្វីយ៉ាឡើហូ វ៉ាឡើមុអវី)** មានន័យថា៖ការសរសើរទាំងឡាយសម្រាប់អល់ឡោះដែលបានផ្ដល់អាហារ និងភេសជ្ជៈដល់យើង និងផ្ដល់ភាពគ្រប់គ្រាន់ដល់យើង ហើយនិងផ្ដល់កន្លែងស្នាក់នៅដល់យើង។មានមនុស្សច្រើនណាស់ដែលមិនបានទទួលនូវប្រការទាំងនេះឡើយ។ |
| اللَّهُمَّ قِنِي عَذَابَكَ، يَوْمَ تَبْعَثُ عِبَادَكَ | **(អល់ឡោះហ៊ុំម៉ាគីណីអាហ្សើពើកើយ៉ៅម៉ាតាប់អាស៊ូអ៊ីពើទើក)** មានន័យថា៖ឱអល់ឡោះជាម្ចាស់របស់ខ្ញុំ!សូមទ្រង់ការពាររូបខ្ញុំអំពីទារុណកម្មរបស់ទ្រង់នៅថ្ងៃដែលទ្រង់ពង្រស់បណ្ដាខ្ញុំបំរើរបស់ទ្រង់ទាំងឡាយឡើងវិញផងចុះ។ |
| باسْمِكَ رَبِّي وَضَعْتُ جَنْبِي، وَبِكَ أَرْفَعُهُ، فَإِنْ أَمْسَكْتُ نَفْسِي فَارْحَمْهَا، وإِنْ أَرْسَلْتَهَا فاحْفَظْهَا، بِمَا تَحْفَظُ بِهِ عِبَادَكَ الصَّالِحِينَ | **(ស៊ិបហាណាកុលឡោះហ៊ុំម៉ារ៉ប់ពី ពីកើវ៉ាហ្វក់តួយ៉ាន់ពី វ៉ាពីកើអារហ្វាអ៊ូហូ អ៊ីនអាំសឹកតាណាហ្វស៊ី ហ្វោគហ៊ីរឡើហើ វ៉ាអ៊ីនអារសាល់តាហើ ហ្វះហ្វស្អហើពីម៉ាតះហ្វាហ្សពីហ៊ីអ៊ីពើទើកាស្ស ស្អរលីហ៊ីន)** មានន័យថា៖ឱអល់ឡោះជាម្ចាស់របស់ខ្ញុំដ៏មហាជ្រះស្អាត នឹងដោយទ្រង់ខ្ញុំសូមដាក់ខ្លួនដេក នឹងដោយទ្រង់ខ្ញុំសូមក្រោកពីដំណេក។ ដូច្នេះបើទ្រង់កំណត់ឱ្យរូបខ្ញុំស្លាប់សូមទ្រង់មេត្តាករុណាដល់រូបខ្ញុំផង តែបើទ្រង់ផ្ដល់ជីវិតឱ្យខ្ញុំទៀតនោះ សូមទ្រង់ថែរក្សារូបខ្ញុំដូចដែលទ្រង់ថែរក្សាបណ្ដាខ្ញុំបំរើដ៏ |





| | |
|---|---|
| | ល្អរបស់ទ្រង់ផងចុះ។ |
| | នៅពេលគាត់ចូលដេក គាត់ផ្លុំដៃទាំងពីររបស់គាត់ និងសូត្រ قُلْ (أَعُوذُ) ទាំងពីរ រួចយកដៃទាំងពីរជូតលើខ្លួនរបស់គាត់។ រៀងរាល់យប់សាហាវីមិនទាន់ចូលដេកទេលុះត្រាតែលោកសូត្រ (الم)ស៊ូរ៉ោះ(سجدة) និង(تبارك)ស៊ូរ៉ោះ(الملك)ហើយសិន។ |
| **ចូលម៉ាស្ជិត** | |
| **នៅពេលចូលក្នុងម៉ាស្ជិតត្រូវចូលជើងស្ដាំមុនរួចពោលថា ៖** بسم اللهِ، وَالصَّلاةُوَالسَّلامُ عَلَى رَسُول اللهاللُّهُمَّ اغفِر لى ذُنوبى وافْتَحْ لِى أَبْوَابَ رَحْمَتِكَ **(ពិសមីលទ្បើហ៊ីវ៉ាសសាឡាមូអាឡើរ៉សូលិលឡើហ៍ អល់ឡោះហុំម៉ោគហ្វីរលីហ្សនូពី វ៉ាហ្វតះលីអាប់វ៉ាពើរ៉ោះម៉ាតិក)** ។ មានន័យថា៖ដោយនាមរបស់អល់ឡោះ និងពជ័យ ព្រមទាំងសេចក្ដីសុខក្សេមក្សាន្តសូមមានដល់រ៉សូលុលឡោះ។ឱអល់ឡោះជាម្ចាស់!សូមទ្រង់បើកបណ្ដាទ្វាររ៉ោះម៉ាត់របស់ទ្រង់សម្រាប់ខ្ញុំផងចុះ។ | |
| **ចេញពី ម៉ាស្ជិត** | |
| **នៅពេលចេញពី ម៉ាស្ជិតត្រូវចេញជើងឆ្វេងមុនរួចពោលថា៖** بِسْمِ اللَّهِ وَالصَّلاةُ وَالسَّلامُ عَلَى رَسُول اللَّهِ، اللَّهُمَّ اغفِرِ لى ذُنُوبى أبوابَ فَضْلِكَ **(ពិសមីលទ្បើហ៊ីវ៉ាសសាឡាមូអាឡើរ៉សូលិលឡើហ៍ អល់ឡោះហុំម៉ោគហ្វីរលីវ៉ាហ្វតះលីអាប់វ៉ាពើហ្វទលិក)** ។ មានន័យថា៖ ដោយនាមរបស់អល់ឡោះ និងពជ័យ ព្រមទាំងសេចក្ដីសុខក្សេមក្សាន្តសូមមានដល់រ៉សូលុលឡោះ។ឱអល់ឡោះជាម្ចាស់!សូមទ្រង់បើកបណ្ដាទ្វារពជ័យរបស់ទ្រង់សម្រាប់ខ្ញុំផងចុះ។ | |
| **ទូអានៅពេលចេញទៅសឡាត** | |
| اللَّهُمَّ اجْعَلْ فِي قَلْبِى نُوراً، وَفِي لِسَانِي نُوراً، وَفِي سَمْعِى نُوراً، وَفِي بَصَري نُوراً، ومِنْ فَوْقِي نُوراً، وَمِنْ تَحْتِى نُوراً، وَعَنْ يَمِينى نُوراً، وَعَنْ شِمَالِي نُوراً، وَمِنْ أمَامِي نُوراً، وَمِنْ خَلْفِى نُوراً، واجْعَلْ فِي نَفْسِى نُوراً، وأَعْظِمْ لِى نُوراً، وَعَظِّمْ لِى نُوراً، واجْعَلْ لِي نُوراً، | **(អល់ឡោះហុំម៉ាជអាល់ហ្វីកល់ពីនូរ៉ វ៉ាហ្វីលីសាណីនូរ៉ វ៉ាហ្វីសាំអ៊ីនូរ៉ វ៉ាហ្វីពើសរីនូរ៉ វ៉ាមិនហ្វៅគីនូរ៉ វ៉ាមិនតះតីនូរ៉ វ៉ាអានយ៉ាមីនីនូរ៉ វ៉ាអាន់ស្ចីម៉ាលីនូរ៉ វ៉ាមិនអាម៉ាមីនូរ៉ វ៉ាមិនខល់ហ្វីនូរ៉ វ៉ាជអាល់ហ្វីណាហ្វស៊ីនូរ៉ វ៉ាអាក់ហ្ស៊ីមលីនូរ៉ វ៉ាអាហ្សហ្ស៊ីមលីនូរ៉ វ៉ាជអាល់លីនូរ៉ វ៉ាជអាល់នីនូរ៉ អល់ឡោះហុំម៉ាអាក់តីនីនូរ៉ វ៉ាជអាល់ហ្វីអាស្វរពីនូរ៉ វ៉ាហ្វីឡះមីនូរ៉ វ៉ាហ្វីទើមីនូរ៉ វ៉ាហ្វិស្វាក់រីនូរ៉ វ៉ាហ្វីពើស្ចើរីនូរ៉)** មានន័យថា៖ឱអល់ឡោះជាម្ចាស់!សូមទ្រង់ឱ្យមានរស្មីក្នុងចិត្តរបស់ខ្ញុំ រស្មីក្នុងអណ្ដាតរបស់ខ្ញុំ រស្មីក្នុងត្រចៀករបស់ខ្ញុំ រស្មីក្នុងផ្នែករបស់ខ្ញុំ រស្មីខាងលើខ្ញុំ រស្មីខាងក្រោមខ្ញុំ រស្មីខាងស្ដាំខ្ញុំ រស្មីខាងឆ្វេងខ្ញុំ រស្មីខាងមុខខ្ញុំ រស្មីខាងក្រោមខ្ញុំ។ |



| | |
|---|---|
| وَاجْعَلْنِي نُوراً، اللَّهُمَّ أَعْطِنِي نُوراً، واجْعَلْ فِي عَصَبِي نُوراً، وَفِي لَحْمِي نُوراً، وَفِي دَمِي نُوراً، وفِي شَعْرِي نُوراً، وفِي بَشَرِي نُوراً | សូមទ្រង់ផ្តល់រស្មីដល់ខ្លួនរបស់ខ្ញុំ រស្មីដ៏ភ្លឺថ្លាដល់រូបខ្ញុំ និងរស្មីដ៏ត្រចះត្រចង់ដល់រូបខ្ញុំ។ ឱអល់ឡោះជាម្ចាស់!សូមផ្តល់រស្មីដ៏ត្រចះត្រចង់ដល់រូបខ្ញុំផង ហើយសូមផ្តល់រស្មីក្នុងសន្លាក់របស់ខ្ញុំ រស្មីក្នុងសាច់របស់ខ្ញុំ រស្មីក្នុងឈាមរបស់ខ្ញុំ រស្មីក្នុងសក់របស់ខ្ញុំ និងរស្មីក្នុងខ្លួនប្រាណរបស់ខ្ញុំផងចុះ។ |

## ទូអារសឡាតអ៊ីសទីខរ៉ះ

**នៅពេលនរណាម្នាក់មានទុក្ខកង្វល់នឹងកិច្ចការអ្វីមួយ ចូរឱ្យគេសឡាតពីររ៉ឹកអាត់មិនមែនហ្វ័រហ្ទូទេ ហើយគេត្រូវសូត្រទូអាថា :**

"اَللَّهُمَّ إِنِّي أَسْتَخِيْرُكَ بِعِلْمِكَ،وَأَسْتَقْدِرُكَ بِقُدْرَتِكَ وَأَسْأَلُكَ مِنْ فَضْلِكَ فَإِنَّكَ تَقْدِرُ وَلاَ أَقْدِرُ وَتَعْلَمُ وَلاَ أَعْلَمُ وَأَنْتَ عَلاَّمُ الْغُيُوْبِ ، اَللَّهُمَّ فَإِنْ كُنْتَ تَعْلَمُ هَذَا الْأَمْرَ

**(អល់ឡោះហុំម៉ាអ៊ិននីអាស់តាខីរ៉ូកើពីអ៊ិលមីកើ វ៉ាសតុកទីរ៉ូកើពីកុទរ៉តីក វ៉ាសអាលូកើមិនហ្វទលីកើ ហ្វាអ៊ិនណាកើតក់ទីរ៉ូវ៉ាឡើអោកទីរ វ៉ាតាក់ឡើមូវ៉ាឡើអាក់ឡាំ វ៉ាអាន់តាអាល់ឡើមុលហ្គុយ៉ូប អាល់ឡោះហុំម៉ាហ្វាអ៊ិនគុនតាតាក់ឡាម៉ូហើហ្សាល់អាំរ៉)**
មានន័យថា៖ ឱអល់ឡោះ! ខ្ញុំសុំជំរើសអំពីទ្រង់ ដោយសារការដឹងរបស់ទ្រង់ ខ្ញុំសុំអំពីទ្រង់ មេត្តាកំណត់(អ្វីដែលល្អអោយខ្ញុំ) ដោយលទ្ធភាពរបស់ទ្រង់ ហើយខ្ញុំសុំអំពីទ្រង់ នូវក្តីករុណាដ៏ធំធេងរបស់ទ្រង់។ ទ្រង់ហើយជាអ្នកមានអានុភាព ចំនែកខ្ញុំគ្មានអានុភាពអ្វីឡើយ។ ទ្រង់ជាអ្នកដឹងបំផុតចំនែកខ្ញុំមិនដឹងឡើយ ហើយទ្រង់ជាអ្នកដឹងនូវប្រការអាថ៌កំបាំងទាំងអស់។ ឱអល់ឡោះ! ប្រសិនបើទ្រង់ដឹងថា កិច្ចការនេះ។

**ហៅឈ្មោះប្រការនោះ** خَيْرًا لِيْ فِيْ دِيْنِيْ وَمَعَاشِيْ وَعَاقِبَةِ أَمْرِيْ **(ខុយរ៉ន់លីហ្វីទីនីវ៉ាម៉ាអាស្ញី វ៉ាអាគីពើតីអាំរី)** មានន័យថា៖ល្អសំរាប់ខ្ញុំ ទាំងផ្នែកសាសនា ការរស់នៅ និងលទ្ធផលចុងក្រោយរបស់ខ្ញុំ។

**ឬសូត្រថា:** عَاجِلِ أَمْرِيْ وَآجِلِهِ- فَاقْدُرْهُ لِيْ وَيَسِّرْهُ لِيْ ثُمَّ بَارِكْ لِيْ فِيْهِ، وَإِنْ كُنْتَ تَعْلَمُ أَنَّ هَذَا الْأَمْرَ شَرٌّ لِيْ فِيْ دِيْنِيْ وَمَعَاشِيْ وَعَاقِبَةِ أَمْرِيْ

**(អាជីលី អាំរីវ៉ាអាជីលីហ- ហ្វាគទូរហ្វូលីវ៉ាយ៉ាសសៀរហ្វូលី ស៊ុម៉ាពើរិកលីហ្វីហ្វីវ៉ាអ៊ិនគុនតាតាក់ឡាមូអាន់ណាហើហ្សាលអាំរ៉ ស្ញើរ៉ន់លីហ្វីទីនី វ៉ាម៉ាអាស្ញី វ៉ាអាគីពើតីអាំរី)** មានន័យថា៖លទ្ធផល នៅពេលបច្ចុប្បន្ន និងអនាគត សូមទ្រង់កំណត់វាអោយខ្ញុំ សំរួលវាអោយខ្ញុំ និងប្រសិទ្ធិពរដល់ខ្ញុំចំពោះវាផង។ ផ្ទុយទៅវិញប្រសិនបើទ្រង់ដឹងថា កិច្ចការនេះអាក្រក់សំរាប់ខ្ញុំ ទាំងផ្នែកសាសនា ការរស់នៅ និងលទ្ធផលចុងក្រោយរបស់ខ្ញុំ។

**ឬសូត្រថា** "فِيْ عَاجِلِ أَمْرِيْ وَآجِلِهِ- فَاصْرِفْهُ عَنِّيْ وَاصْرِفْنِيْ عَنْهُ وَاقْدُرْ لِيَ الْخَيْرَ حَيْثُ كَانَ ثُمَّ رَضِّنِيْ بِهِ **(ហ្វីអាជីលីអាំរីវ៉ាអាជីលីហ៊ី- ហ្វាសរីហ្វហូ អាន់នីវ៉ាស្វរីហ្វនីអាន់ហូ វក់ទូរលីខុយរ៉ហៃស៊ូកើណាស៊ុមម៉ារ៉ទទីនីពីហ៊)** មានន័យថា៖លទ្ធផល បច្ចុប្បន្នរបស់ខ្ញុំ និង





អនាគត សូមទ្រង់មេត្តាបញ្ចៀសវាអំពីខ្ញុំ បញ្ចៀសខ្ញុំអំពីវា និងកំណត់អោយខ្ញុំនូវអ្វីដែលល្អទោះជានៅទីកន្លែង និងពេលណាក៏ដោយ បន្ទាប់ មកសូមទ្រង់អោយខ្ញុំមានចិត្តស្កប់ស្កល់ចំពោះវាផង។

## ទូអាឱ្យសាកសព

| | |
|---|---|
| اللَّهُمَّ اغْفِرْ لَهُ وارْحَمْهُ، وعَافِهِ، واعْفُ عَنْهُ، وأَكْرِمْ نُزُلَهُ، وَوَسِّعْ مُدْخَلَهُ، واغْسِلهُ بالمَاءِ والثَّلْجِ والبَرَدِ، ونَقِّهِ مِنَ الخَطَايَا كَمَا نَقَّيْتَ الثَّوْبَ الأَبْيَضَ مِنَ الدَّنَسِ، وأَبْدِلْهُ دَاراً خَيْراً مِنْ دَارِهِ، وأَهْلاً خَيْراً مِنْ أَهْلِهِ، وزَوْجاً خَيْراً مِنْ زَوْجِهِ، وأَدْخِلْهُ الجَنَّةَ، وأَعِذْهُ مِنْ عَذَابِ القَبْرِ وَعَذَابِ النَّارِ | (អល់ឡោះហុំម៉ោគហ្វីរឡើហ្ វ៉ារហាំហ្ វ៉ាអាហ្វីហ៊ីវ៉ាក់ហ្វអាន់ហ្ វ៉ាអ៉ីករីមនូហ្សូឡើហ្ វ៉ាវ៉ាសសាក់មុទខឡើហ្ វ៉ាគសិលហូពិលម៉ាអ៊ី វ៉ាសសាល់ជី វ៉ាល់ពើរ៉ទី វ៉ាណុកគីហ៊ីមិនខតយ៉ាកើម៉ាណុកកុយតាសសៅប៉ាល់អាប់យ៉ាទូមីណាត់ទើណាស វ៉ាអាប់ទីលហូទើរ៉ន់ខុយរ៉ន់មិនទើរីហ៊ី វ៉ាអះឡាន់ខុយរ៉ន់មិនអះលីហ៊ី វ៉ាហ្សៅជ៉ន ខុយរ៉ន់មិនហ្សៅជីហ៊ី វ៉ាអាទខីលហូលយ៉ាន់ណាតា វ៉ាអាអ៊ីស្ហូមិនអាហ្សើបពិលកប៉រី វ៉ាមិនអាហ្សើបពិនណារ) មានន័យថា៖ឱអល់ឡោះជាម្ចាស់!សូមទ្រង់មេត្តាអភ័យទោសចំពោះគាត់ និងសណ្ដោះប្រណីដល់គាត់។ឱអល់ឡោះសូមទ្រង់មេត្តាសណ្ដោះប្រណីចំពោះទោសកំហុស និងអភ័យទោសដល់គាត់ផង។ឱអល់ឡោះ!សូមទ្រង់លើកដំកើង និងពង្រីកផ្នូររបស់គាត់ ហើយជំរះគាត់ដោយទឹក ទឹកកក និងទឹកព្រិល ព្រមទាំងជំរះគាត់ឱ្យជ្រះស្អាត់ពីអំពើខុសឆ្គងទាំងឡាយប្រៀបដូចជាអ្នកសម្អាត់សំលៀកបំពាក់ពណ៌សឱ្យជ្រះស្អាត់ពីភាពកខ្វក់។សូមទ្រង់ផ្លាស់ប្ដូរឱ្យនូវកន្លែងដែលល្អប្រសើរជាងកន្លែងដែលគាត់បានរស់នៅក្នុងលោកិយ៍ និងគ្រួសារដែលល្អជាងគ្រួសារគាត់ ព្រមទាំងប្រពន្ធដែលល្អជាងប្រពន្ធគាត់។ ឱអល់ឡោះ!សូមទ្រង់បញ្ចូលគាត់ទៅក្នុងឋានសួគ៌ និងបញ្ចៀសរូបគាត់ពីទណ្ឌកម្មក្នុងផ្នូរ និងទណ្ឌកម្មនៃភ្លើងនរក។ |

## ទូអារំលែកទុក្ខ

នៅពេលដែលបុគ្គលម្នាក់វាមានការកើតទុក្ខ និងការព្រួយបារម្ភណ៍ ហើយគេបានពោលថា៖

اللَّهُمَّ إِنِّي عَبْدُكَ، ابْنُ عَبدِكَ، ابْنُ أَمَتِكَ، نَاصِيَتِي بِيَدِكَ، مَاضٍ فِيَّ حُكْمُكَ، عَدْلٌ فِيَّ قَضَاؤُكَ، أَسْأَلُكَ بِكُلِّ اسْمٍ هُوَ لَكَ، سَمَّيْتَ بِهِ نَفْسَكَ، أَوْ أَنْزَلْتَهُ فِي كِتَابِكَ، أَوْ عَلَّمْتَهُ أَحَداً مِنْ خَلْقِكَ، أَو اسْتَأْثَرْتَ بِهِ فِي عِلْمِ الغَيْبِ عِنْدَكَ، أَنْ تَجْعَلَ القُرْآنَ رَبِيْعَ قَلْبِي، وَنُورَ صَدْرِي، وجَلاءَ حُزْنِي، وَذَهَابَ هَمِّي

(អល់ឡោះហុំម៉ាអ៊ីននីអាប់ទូកើ វ៉ាអ៊ីបនូអាប់ទីកើ វ៉ាអ៊ីបនូអាម៉ាតិក ណាស៊្វីយ៉ាតីពីយ៉ាទិក ម៉ាទិនហ្វីយ៉ាហុកមុក អាទលុនហ្វីយ៉ាក៏ហ្សអុក អាស់អាលូកើពីកុលលីអ៊ីសមិនហូវ៉ាលឹក សាំម៉ៃតាពីហ៊ីណាហ្វសឹក អៅអាន់អាល់ឡាំតាហូអាហាទ័ន មិនខុលគីក អៅអាន់ហ្សាល់តាហូហ្វីគីតាពិក អៅអ៊ីសតាក់សើរតាពីហ៊ីហ្វីអ៊ីលមិល



**ហ្គយពីអ៊ីនឌីក អាន់តាជអាលាល់គួរអាណាវ៉ាពៀអាគូលូពី វ៉ានូរ៉ស្ទទរី វ៉ាជីឡើអា ហ៊ុហ្សណី វ៉ាហ្សើហើពើហាំមី)** មានន័យថា៖ឱអល់ឡោះជាម្ចាស់! ប្រាកដណាស់ រូបខ្ញុំជាខ្ញុំបំរើរបស់ទ្រង់ និងជាកូននៃខ្ញុំបំរើរបស់ទ្រង(ណាពីអាដាំ)ម្នាក់ និងជា កូនខ្ញុំបំរើស្រីរបស់ទ្រង់(ហាវ៉ើ)។រូបខ្ញុំស្ថិតក្នុងកណ្តាប់ដៃរបស់ទ្រង់។បទបញ្ជា របស់ទ្រង់មកលើរូបខ្ញុំត្រូវបានអនុវត្ត ហើយការកំណត់ទាំងឡាយរបស់ទ្រង់មក លើរូបខ្ញុំគឺពិតជាត្រឹមត្រូវណាស់។ខ្ញុំសុំពីទ្រង់នឹងនាងទាំងឡាយរបស់ទ្រង់ដែល ទ្រង់បានដាក់នាមទាំងនោះដោយខ្លួនទ្រង់ផ្ទាល់ ឬនាមដែលទ្រង់បានបញ្ចុះមក ក្នុងគីតាបរបស់ទ្រង់ ឬទ្រង់បានបង្រៀនន រណាម្នាក់ក្នុងចំណោមខ្ញុំរបស់ទ្រង់ ឬក៏ នាមដែលទ្រង់បានថែរក្សាវាទុកដោយការដឹងនូវរឿងអាថ៌កំបាំងដែលទ្រង់មាន (តាមរយៈនាមទាំងនោះ)។ខ្ញុំសុំពីទ្រង់ឱ្យគួរអានក្លាយជាភាពស្រស់ថ្លានៃបេះដូង របស់ខ្ញុំ ជារស្មីនៃទ្រូងរបស់ខ្ញុំជាការបំបាត់នៃភាពទុក្ខព្រួយរបស់ខ្ញុំ និងជាការ ឃ្លាតឆ្ងាយនៃកង្វល់របស់ខ្ញុំ។

លើកលែងតែអល់ឡោះបានបញ្ចៀសនូវការកើតទុក្ខ និងការព្រួយបារម្ភណ៍ ហើយផ្លាស់ប្តូរមកវិញនូវភាពសប្បាយរីករាយ។





# ការជួញដូរដែលចំណេញ

អល់ឡោះបានលើកតំកើងមនុស្សឱ្យប្រសើរលើសសត្វលោកដទៃទៀត។ ទ្រង់ផ្តល់ជាពិសេសដល់មនុស្សគឺគេអាចនិយាយបាន ហើយឧបករណ៍របស់វាគឺអណ្តាត។ វាជាណៀកម៉ាត់ដែលគេប្រើប្រាស់ក្នុងអំពើល្អ និងអំពើអាក្រក់។ នរណាប្រើប្រាស់វាក្នុងអំពើល្អគឺគេនឹងទទួលបានសុភមង្គលនៅក្នុងលោកីយ៍នេះ ហើយមានឋានៈខ្ពង់ខ្ពស់នៅក្នុងឋានសួគ៌ ។ ឯចំណែកនរណាដែលប្រើប្រាស់វាក្រៅពីនោះគឺវានឹងធ្វើឱ្យគេវិនាសទាំងក្នុងលោកីយ៍នេះ និងថ្ងៃអាឃីរ៉ាត់។ ការប្រើប្រាស់ដ៏ប្រសើរបំផុត បន្ទាប់ពីសូត្រអាល់គួរអាននោះគឺហ្ស៊ីកៀរចំពោះអល់ឡោះ។

ឧត្តមភាពនៃការហ្ស៊ីកៀរចំពោះអល់ឡោះមានហាទីសជាច្រើនដែលបាននិយាយទាក់ទងនឹងរឿងនោះ ដូចជា : មានន័យថា : «តើពួកអ្នកចង់ឱ្យខ្ញុំប្រាប់ពួកអ្នកទេ អំពីអំពើដែលល្អសំរាប់ពួកអ្នក ស្អាតស្អំបំផុតចំពោះម្ចាស់របស់ពួកអ្នក មានឋានៈខ្ពស់បំផុត ល្អជាងការបរិច្ចាគ មាស ប្រាក់ និងល្អជាងពេលដែលពួកអ្នកជួបសត្រូវរបស់ពួកអ្នក ពួកអ្នកសម្លាប់ពួកគេ ហើយពួកគេសម្លាប់ពួកអ្នកវិញ។ ពួកគេបានឆ្លើយថា បាទចង់។ ណាពីបានមានប្រសាសថា : គឺការរំឭក ហ្ស៊ីកៀរចំពោះអល់ឡោះ»។(អាត់តៀរមីហ្ស៊ី)

មានន័យថា: «ប្រៀបធៀបអ្នកដែលហ្ស៊ីកៀរចំពោះម្ចាស់របស់គេនិងអ្នកដែលមិនហ្ស៊ីកៀរចំពោះម្ចាស់របស់គេនោះប្រៀបដូចជាមនុស្សរស់ និងមនុស្សស្លាប់»។(អាល់ពូខរី និងមូស្លីម)

មានន័យថា: «អល់ឡោះបានមានព្រះបន្ទូលថា យើងឆ្លើយតបនឹងខ្ញុំបម្រើយើងអាស្រ័យតាមការគិតរបស់គេចំពោះយើង។ យើងនៅជាមួយនឹងគេ នៅពេលគេរំឭកមកចំពោះយើង។ ហេតុនេះនៅពេលដែលគេរំឭកមកចំពោះយើងនៅក្នុងខ្លួនរបស់គេ យើងនឹងរំឭកពីគេវិញនៅក្នុងខ្លួនរបស់យើង។ ប្រសិនបើគេរំឭកមកចំពោះយើងនៅក្នុងក្រុមមួយ យើងរំឭកពីគេវិញនៅក្នុងក្រុមមួយដែលល្អជាងក្រុមរបស់ពួកគេ។ បើសិនជាគេបញ្ជិតខ្លួនមកចំពោះយើងចំនួនមួយចំអាម យើងនឹងខិតទៅជិតគេមួយហត្ថវិញ»។(អាល់ពូខរី)

មានន័យថា : «ពួកមូហ្វើរីទូន(លះបង់ខ្លួន)បានទៅមុនហើយ។ ពួកគេបានសួរថា តើពួកមូហ្វើរីទូនជាក្រុមណា? គាត់បានតបវិញថា : គឺពួកអ្នកដែលរំឭកចំពោះអល់ឡោះយ៉ាងច្រើនបំផុតទាំងបុរសទាំងស្ត្រី»។(មូស្លីម)

មានន័យថា: «ណាពីបានផ្តែផ្តាំសហាហ្ពាត់របស់គាត់ម្នាក់ថា ចូរឱ្យអណ្តាតរបស់អ្នកនៅសើមរហូតជាមួយនឹងការហ្ស៊ីកៀរចំពោះអល់ឡោះ»។(អាត់តៀរមីហ្ស៊ី) នៅ



មានហាទីសផ្សេងៗទៀត។

ផលបុណ្យកើនទ្វេដង: អំពើកុសលបានទទួលផលបុណ្យទ្វេដង ដូចផលបុណ្យនៃការសូត្រអាល់គួរអានដោយសារ :

១.អាស្រ័យលើជំនឿ ចិត្តសទ្ធាជ្រះថ្លា និងការស្រលាញ់អល់ឡោះដែលមាននៅក្នុងដួងចិត្ត និងប្រការបន្ទាប់បន្សំផ្សេងទៀត។

២.អាស្រ័យលើចិត្តដែលគិតនិងយកចិត្តទុកដាក់ចំពោះការហ្ស៊ីកៀរ មិនមែនត្រឹមតែលើ

អណ្តាតប៉ុណ្ណោះទេ។

បើប្រការទាំងនោះប្រតិបត្តិបានល្អគ្រប់លក្ខណៈគឺអល់ឡោះនឹងជម្រុះនូវអំពើបាបរបស់គេទាំងអស់ ហើយបន្ថែមផលបុណ្យឱ្យគេយ៉ាងច្រើនសន្ធឹកសន្ធាប់។ បើសិនជាខ្វះខាតវិញគឺបណ្តាលមកពីខ្លួនគេផ្ទាល់។

ផលប្រយោជន៍ហ្ស៊ីកៀរ: បណ្តេញស្ហៃតន ប្រមាថវា និងធ្វើឱ្យវាអាប់ឱន ហើយធ្វើឱ្យម្ចាស់ដ៏មហាមេត្តាទ្រង់សព្វព្រះទ័យ។

✷នាំមកនូវសេចក្តីស្រលាញ់ចំពោះអល់ឡោះ និងបញ្ចិតខ្លួនចំពោះទ្រង់ ដឹងពីការឃ្លាំមើលរបស់ទ្រង់ និងកោតខ្លាចចំពោះទ្រង់ វិលត្រលប់ទៅរកទ្រង់ និងជាជំនួយដល់គេក្នុងការប្រតិបត្តិចំពោះទ្រង់។ ✷ ជួយបំបាត់ទុក្ខកង្វល់ពីក្នុងដួងចិត្ត នាំមកនូវភាពរីករាយ ធ្វើឱ្យដួងចិត្តរស់ មានកម្លាំងថាមពល និងជ្រះថ្លា។ ✷ក្នុងដួងចិត្តមានតម្រូវការ និងកង្វះខាតដែលគ្មានអ្វីបំពេញវា ក្រៅពីការហ្ស៊ីកៀរចំពោះអល់ឡោះ។ ដួងចិត្តរឹងរូសគ្មានអ្វីលុបបំបាត់វា ហើយគ្មានអ្វីអាចបន្ទន់វាក្រៅពីការហ្ស៊ីកៀរចំពោះអល់ឡោះ។ ✷ ការហ្ស៊ីកៀរជាការព្យាបាល និងជាឱសថសម្រាប់ដួងចិត្ត និងជាកម្លាំងដួងចិត្ត ភាពផ្អែមល្ហែមនេះគ្មានអ្វីប្រៀបស្មើបាន ហើយការភ្លេចហ្ស៊ីកៀរជាជំងឺដួងចិត្ត។ ✷ការហ្ស៊ីកៀរតិចគឺជាសញ្ញាសំគាល់នៃភាពជាមូណាហ្វិក ហើយការហ្ស៊ីកៀរច្រើនជាសញ្ញាសម្គាល់ពីភាពខ្លាំងក្លានៃជំនឿ និងស្រលាញ់ស្មោះត្រង់ចំពោះអល់ឡោះ។ ពីព្រោះថា នរណាម្នាក់ស្រលាញ់អ្វីមួយគេតែងរំឭកពីរបស់នោះ។ ✷ខ្ញុំរបស់អល់ឡោះ នៅពេលស្គាល់អល់ឡោះដោយការហ្ស៊ីកៀរក្នុងពេលស្រណុកសុខស្រួល គឺទ្រង់នឹងស្គាល់គេវិញនៅពេលមានទុក្ខលំបាក។ ជាពិសេសនៅពេលជិតស្លាប់ និងដង្ហើមចង្រិត។ ✷ជាមូលហេតុនាំឱ្យរួចផុតពីទារុណកម្មរបស់អល់ឡោះ ដាក់ចុះមកនូវភាពនឹងនរគ្របដណ្តប់ដោយក្តីមេត្តាករុណា និងការសុំអភ័យទោសឱ្យ ពីសំណាក់ពួកទេវតា។ ✷ធ្វើឱ្យអណ្តាតមិនរវល់ជាមួយនឹងការនិយាយលេងសើចឥតប្រយោជន៍ និយាយដើមគេ និយាយបង្ខូចគេ និយាយកុហក និងប្រការផ្សេងទៀតដែលស្ថិត

ក្នុងប្រការដែលគេហាមឃាត់ និងស្អប់ខ្ពើម។ ✱ជាការប្រតិបត្តិដែលងាយស្រួលបំផុត តែថ្កុំថ្កើងជាងគេ ប្រសើរជាងគេ។ វាគឺជាកូនឈើដែលគេដាំនៅក្នុងឋានសួគ៌។ ✱អ្នកដែលហ្ស៊ីកៀរលម្អដោយភាពកោតញញើត ស្រស់ស្រាយ និងទឹកមុខស្រស់បស់។ ហ្ស៊ីកៀរជាពន្លឺនៅក្នុងលោកីយ៍ នៅក្នុងផ្នូរ និងនៅថ្ងៃអាឃីរ៉ាត់។ ✱អល់ឡោះនិងទេវតារបស់ទ្រង់ជូនពរជ័យចំពោះអ្នកដែលហ្ស៊ីកៀរ។ ✱អល់ឡោះទ្រង់យកអ្នកដែលហ្ស៊ីកៀរទៅសរសើរប្រាប់ពួកទេវតារបស់ទ្រង់។ ✱អ្នកដែលមានអំពើល្អប្រសើរជាងគេគឺអ្នកដែលហ្ស៊ីកៀរច្រើនជាងគេ ហើយអ្នកបួសដែលបួសល្អជាងគេគឺអ្នកបួសដែលហ្ស៊ីកៀរចំពោះអល់ឡោះច្រើនជាងគេ។ ✱ធ្វើឱ្យការងារពិបាកក្លាយជាស្រួល ធ្ងន់ប្រែជាស្រាល ឧបសគ្គតានតឹងប្រែជាធូរស្រាល នាំមកនូវលាបសក្ការៈ និងពង្រឹងសុខភាពផ្លូវកាយ។

**ផលប្រយោជន៍:** ស៊ៀខឥស្លាមបាននិយាយថា ការហ្ស៊ីកៀរសម្រាប់ដួងចិត្តប្រៀបដូចជាទឹកសម្រាប់ត្រី ចុះបើត្រីចាកទឹក នឹងក្លាយជាយ៉ាងណា?

| ការហ្ស៊ីកៀរប្រចាំថ្ងៃ | | | | | | |
|---|---|---|---|---|---|---|
| ១ | សូត្រអាយ៉ាត់គួរស៊ី<br>﴿ ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ٱلۡحَيُّ ٱلۡقَيُّومُۚ لَا تَأۡخُذُهُۥ سِنَةٞ وَلَا نَوۡمٞۚ لَّهُۥ مَا فِي ٱلسَّمَٰوَٰتِ وَمَا فِي ٱلۡأَرۡضِۗ مَن ذَا ٱلَّذِي يَشۡفَعُ عِندَهُۥٓ إِلَّا بِإِذۡنِهِۦۚ يَعۡلَمُ مَا بَيۡنَ أَيۡدِيهِمۡ وَمَا خَلۡفَهُمۡۖ وَلَا يُحِيطُونَ بِشَيۡءٖ مِّنۡ عِلۡمِهِۦٓ إِلَّا بِمَا شَآءَۚ وَسِعَ كُرۡسِيُّهُ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضَۖ وَلَا يَـُٔودُهُۥ حِفۡظُهُمَاۚ وَهُوَ ٱلۡعَلِيُّ ٱلۡعَظِيمُ ﴿٢٥٥﴾ ﴾ | | | | | |
| ចំនួននិងពេលវេលា | ព្រឹកម្ដងល្ងាចម្ដងនិងបន្ទាប់ពីសឡាតហ្វ៊រហ្ទូ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ស្សេទ្ធូនមិនហានមកជិត និងជាមូលហេតុនាំឱ្យចូលឋានសួគ៌ | | | |
| ២ | សូត្រពីរអាយ៉ាត់ចុងក្រោយនៃសូរ៉ោះអាល់ហ្ពាករ៉ោះ<br>﴿ ءَامَنَ ٱلرَّسُولُ بِمَآ أُنزِلَ إِلَيۡهِ مِن رَّبِّهِۦ وَٱلۡمُؤۡمِنُونَۚ كُلٌّ ءَامَنَ بِٱللَّهِ وَمَلَٰٓئِكَتِهِۦ وَكُتُبِهِۦ وَرُسُلِهِۦ لَا نُفَرِّقُ بَيۡنَ أَحَدٖ مِّن رُّسُلِهِۦۚ وَقَالُواْ سَمِعۡنَا وَأَطَعۡنَاۖ غُفۡرَانَكَ رَبَّنَا وَإِلَيۡكَ ٱلۡمَصِيرُ ﴿٢٨٥﴾ لَا يُكَلِّفُ ٱللَّهُ نَفۡسًا إِلَّا وُسۡعَهَاۚ لَهَا مَا كَسَبَتۡ وَعَلَيۡهَا مَا ٱكۡتَسَبَتۡۗ رَبَّنَا لَا تُؤَاخِذۡنَآ إِن نَّسِينَآ أَوۡ أَخۡطَأۡنَاۚ رَبَّنَا وَلَا تَحۡمِلۡ عَلَيۡنَآ إِصۡرٗا كَمَا حَمَلۡتَهُۥ عَلَى ٱلَّذِينَ مِن قَبۡلِنَاۚ رَبَّنَا وَلَا تُحَمِّلۡنَا مَا لَا طَاقَةَ لَنَا بِهِۦۖ وَٱعۡفُ عَنَّا وَٱغۡفِرۡ لَنَا وَٱرۡحَمۡنَآۚ أَنتَ مَوۡلَىٰنَا فَٱنصُرۡنَا عَلَى ٱلۡقَوۡمِ ٱلۡكَٰفِرِينَ ﴾ | | | | | |
| ចំនួននិងពេលវេលា | ល្ងាចម្ដងនិងមុនដេកនិងសូត្រក្នុងផ្ទះបានគ្រប់ពេល | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ការពារពីអំពើអាក្រក់គ្រប់បែបយ៉ាង | | | |
| ៣ | សូត្រស៊ូរ៉ោះអៀកខ្លាស និង ទាំងពីរ<br>﴿ قُلۡ هُوَ ٱللَّهُ أَحَدٌ ﴾ ﴿ قُلۡ أَعُوذُ بِرَبِّ ٱلۡفَلَقِ ﴾ ﴿ قُلۡ أَعُوذُ بِرَبِّ ٱلنَّاسِ ﴾ | | | | | |
| ចំនួននិងពេលវេលា | ព្រឹក៣ដងល្ងាច៣ដង | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ការពារគេពីអ្វីគ្រប់យ៉ាង | | | |



**៤** بِسْمِ اللهِ الَّذِي لا يَضُرُّ مَعَ اسْمِهِ شَيءٌ فِى الأَرْضِ وَلا فِي السَّمَاءِ وهُوَ السَّمِيعُ العَلِيْمُ

**(ពិសមីលឡើហ៊ីលឡើហ្ស៊ី ឡើយ៉ាទួរវ៉ូម៉ាអាសមីហ៊ីស្ហៃអុន ហ្វីលអោរហ្ឌី វ៉ាឡើហ្វីសសើម៉ាអ វ៉ាហ៊ូវ៉ាសសើមីអុលអាលីម)** មានន័យថា៖ដោយនាមរបស់អល់ឡោះដែលគ្មានអ្វីមួយលើផែនដីនិងនៅលើមេឃអាចធ្វើឱ្យមានគ្រោះមហន្តរាយបានឡើយ ទ្រង់មហាលឺនិងមហាដឹង។

| | | | |
|---|---|---|---|
| មិនកើតគ្រោះថ្នាក់ដោយទាន់ហន់ហើយគ្មានអ្វីបង្កគ្រោះថ្នាក់ដល់គេ។ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក៣ ល្ងាច៣ | ចំនួននិងពេលវេលា |

**៥** أَعُوْذُ بِكَلِمَاتِ اللهِ التَّامَّاتِ مِنْ شَرِّ مَا خَلَقَ

**(អាអ៊ូហ្សូពីកើលីម៉ាតីលឡើហ៊ីតតាមម៉ាតី មិនស្ហើររីម៉ាខឡក់)** មានន័យថា៖ខ្ញុំសុំពីអល់ឡោះតាមរយៈពាក្យពេចន៍ដ៏ពេញលេញរបស់ទ្រង់ សូមបញ្ចៀសរូបខ្ញុំពីប្រការអាក្រក់ដែលទ្រង់បានបង្កើតផងចុះ។

| | | | |
|---|---|---|---|
| ការពារទីកន្លែងនានាពីគ្រោះថ្នាក់ទាំងឡាយ។ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ល្ងាច៣និងពេលចុះពីផ្ទះ | ចំនួននិងពេលវេលា |

**៦** حَسْبِيَ اللهُ لاَ إِلَهَ إلاَّ هُوَ عَلَيْهِ تَوَكَّلتُ، وَهُوَ رَبُّ العَرْش العَظِيم

**(ហាសពីយ៉ល់ឡោះហ៊ូឡើអ៊ីឡើហើ អ៊ីលឡើហ៊ូវ៉ាអាឡៃហ៊ីតាវ៉ាក់កឹលតូ វ៉ាហ៊ូវ៉ារ៉ប់ពុលអោរស្ហីលអាហ្ស៊ីម)** មានន័យថា៖មានតែអល់ឡោះមួយគត់ គឺគ្រប់គ្រាន់ ហើយសម្រាប់រូបខ្ញុំ។គ្មានទេម្ចាស់ដែលត្រូវគេគោរពយ៉ាងពិតប្រាកដ លើកលែងតែអល់ឡោះដែលខ្ញុំសូមប្រគល់ខ្លួនជូនទាំងស្រុង ហើយអល់ឡោះ គឺជាម្ចាស់អារ៉ស្ស ដ៏សែនធំ។

| | | | |
|---|---|---|---|
| អល់ឡោះបញ្ចៀសគេពីទុក្ខកង្វល់ទាំងកិច្ចការលោកីយ៍និងអាឃីរ៉ាត់។ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក៧ដង ល្ងាច៧ដង | ចំនួននិងពេលវេលា |

**៧** رَضِيْتُ باللهِ رَبًّا، وبالإِسْلامِ دِيْناً، وبمُحَمَّدٍ نَبِيًّا

**(រ៉ឌីតូពិលឡើហ៊ីរ៉ប់តើ វ៉ាពិលអ៊ីស្លាមីទីណា វ៉ាពីម៉ូហាំម៉ាទិន ណាពីណា)** មានន័យថា៖ខ្ញុំព្រមទទួលថាអល់ឡោះជាម្ចាស់ ហើយឥស្លាមជាសាសនាមួយ ព្រមទាំងមូហាំម៉ាត់ជាណាពី។

| | | | |
|---|---|---|---|
| អល់ឡោះចាំបាច់ត្រូវតែសព្វព្រះទ័យចំពោះគេ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក៣ដង ល្ងាច៣ដង | ចំនួននិងពេលវេលា |

**៨** اللَّهُمَّ بكَ أَصْبَحْنَا، وبكَ أَمْسَيْنَا، وَبكَ نَحْيَا، وَبكَ نَمُوتُ، وإِلَيْكَ النُّشُورُ

**(អល់ឡោះហ៊ុំម៉ាពីកើ អោស្ហហ្ហះណា វ៉ាពីកើអាំសៃណា វ៉ាពីកើណះយ៉ា វ៉ាពីកើណាមូ៊តូ វ៉ាអ៊ីឡៃកាន់នូស្ហូរ)** មានន័យថា៖ឱអល់ឡោះ!ដោយសារទ្រង់ដែលពួកយើងបានឈានចូលព្រឹកនេះ ហើយដោយសារទ្រង់ដែរដែលពួកយើងបានឈានចូលដល់ពេលល្ងាចនេះ។ដោយសារតែទ្រង់ដែលពួកយើងបានរស់រានមានជីវិត និងដោយសារទ្រង់ផងដែរដែលពួកយើងនឹងត្រូវស្លាប់។ពួកយើងត្រូវវិលទៅរកទ្រង់។




នៅពេលល្ងាច اللَّهُمَّ بِكَ أَمْسَيْنَا، وَبِكَ أَصْبَحْنَا، وَبِكَ نَحْيَا، وَبِكَ نَمُوتُ، وَإِلَيْكَ الْمَصِيرُ (អល់ឡោះហ៊ុំម៉ាពីកើអាំសៃណា វ៉ាពីកើអោស្ហប្ហះណា វ៉ាពីកើណ៉ះយ៉ា វ៉ាពីកើណាម៊ូតូ វ៉ាអ៊ីឡៃកាល់ម៉ាស៊ីរ) អត្ថន័យប្រហាក់ប្រហែលខាងលើដែរ។

| មានហាទីសជំរុញក្នុងការហ្សិកៀរនេះ។ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក១ដង ល្ងាច ១ដង | ចំនួននិងពេលវេលា |
|---|---|---|---|
| ៩ | أَصْبَحْنَا عَلَى فِطْرَةِ الإِسْلامِ، وَعَلَى كَلِمَةِ الإِخْلاصِ، وَعَلَى دِيْنِ نَبِيِّنَا مُحَمَّدٍ، وَعَلَى مِلَّةِ أَبِينَا إِبْرَاهِيمَ، حَنِيفاً مُسْلِماً وَمَا كَانَ مِنَ الْمُشْرِكِينَ | | |

(អោស្ហប្ហះណា អាឡើហ្វិតរ៉តីលអ៊ីស្លាម វ៉ាគើលីម៉ាតីលអ៊ិខឡស វ៉ាអាឡើទីនី ណាពីយ៉ីណា ម៉ូហាំម៉ាត់ សល់លុលឡោះហ៊្វអាឡៃហ៊ីវ៉ាសាលឡាំ វ៉ាអាឡើម៉ីលឡើតី អាពីណាអ៊ីពរ៉ហ៊ីម ហានីហ្វាន់ មូស្លីម៉ា វ៉ាម៉ាកើណាមីណាល់មូស្ហរីគីន) មានន័យថា៖ពួកយើងខ្ញុំបានចូលមកដល់ពេលព្រឹកព្រលឹមក្នុងដើមកំណើតកាន់សាសនាឥស្លាម និងលើពាក្យសំដីដ៏ជ្រះស្អាត ហើយនៅក្នុងសាសនាណាពីរបស់យើងម៉ូហាំម៉ាត់ ព្រមទាំងនៅក្នុងសាសនាឪពុករបស់យើងណាពីអ៊ីបរ៉ហ៊ីមដែលប្រកាន់យកផ្លូវដ៏ត្រឹមត្រូវជាអ្នកមូស្លីមដ៏ស្អាតស្អំ។អ៊ីបរ៉ហ៊ីមមិនមែនស្ថិតនៅក្នុងចំណោមពពួកអ្នកពហុទេពនិយមឡើយ។

| ណាពីទូអាវ៉ា | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ម្តងនៅពេលព្រឹក | ចំនួននិងពេលវេលា |
|---|---|---|---|
| ១០ | اللَّهُمَّ مَا أَصْبَحَ بِي مِنْ نِعْمَةٍ، أَوْ بِأَحَدٍ مِنْ خَلْقِكَ، فَمِنْكَ وَحْدَكَ لا شَرِيْكَ لَكَ، فَلَكَ الحَمْدُ وَلَكَ الشُّكْرُ | | |

(អល់ឡោះហ៊ុំម៉ាអ៊ីនណី អោស្ហប្ហះតូមិនកើហ្វី នៃកម៉ាតីន វ៉ាអាហ្វីយ៉ាតីន វ៉ាស៊ីតរីនហ្វាអាត់ម៉ឹម នៃកម៉ាតាកើ អាឡៃយ៉ា វ៉ាអាហ្វីយ៉ាតាកើ វ៉ាស៊ីតរ៉កើហ្វីទទុនយ៉ា វ៉ាល់អាខីរ៉ោះ) មានន័យថា៖ឱអល់ឡោះជាម្ចាស់!ដោយសារទ្រង់យើងខ្ញុំបានចូលមកដល់ពេលព្រលឹមដោយលាភសក្ការៈ និងការថែរក្សា និងការបិទបាំង សូមទ្រង់បំពេញនូវលាភសក្ការៈរបស់ទ្រង់ដល់ខ្ញុំផង និងការថែរក្សា និងការបិទបាំងរបស់ទ្រង់ក្នុងលោកិយ៍ និងថ្ងៃបរលោក។

នៅពេលល្ងាយ ........اللَّهُمَّ إِنِّي أَمْسَيْتُ (អល់ឡោះហ៊ុំម៉ាអ៊ីនណី អាំសៃតូ.....)

| អល់ឡោះចាំបាច់ត្រូវផ្តល់លាភសក្ការៈឱ្យគេ ការពារគេ និងបិទបាំងគេ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក១ដង ល្ងាច១ដង | ចំនួននិងពេលវេលា |
|---|---|---|---|
| ១១ | اللَّهُمَّ إِنِّي أَصْبَحْتُ أُشْهِدُكَ، وَأُشْهِدُ حَمَلَةَ عَرْشِكَ، وَمَلائِكَتَكَ، وَجَمِيْعَ خَلْقِكَ، أَنَّكَ أَنْتَ اللهُ لا إِلَهَ إِلاَّ أَنْتَ وَحْدَكَ لا شَرِيْكَ لَكَ، وَأَنَّ مُحَمَّداً عَبْدُكَ وَرَسُولُكَ | | |

(អល់ឡោះហ៊ុំម៉ាអ៊ីនណីអ៊ុស្ហហ៊ីទូកើ វ៉ាអ៊ូស្ហហ៊ីទូហាម៉ាឡាតាអោរស៊ីកើ វ៉ាម៉ាឡើអ៊ីកើតីកើ វ៉ាអាំពីយ៉ាអ៊ីកើ វ៉ាជើមៀអាខល់គីកើ ពីអាន់ណាកើអាន់តល់ឡោះហ្វឡើអ៊ីឡើហើអ៊ីលឡើអាន់តា វ៉ាអាន់ណាមូហាំម៉ាទ័ន អាប់ទូកើវ៉ារ៉សូលូកើ) មានន័យថា៖ឱអល់ឡោះជាម្ចាស់!ពិតប្រាកដណាស់ខ្ញុំសូមយកទ្រង់ជាសក្សីថាទ្រង់ជាអល់ឡោះបន្ទាប់មកទៀត ខ្ញុំសូមធ្វើសាក្សីចំពោះម៉ាឡើអ៊ីកាត់ដែលទ្រអារ៉ស្សរបស់អល់ឡោះ និងម៉ាឡើអ៊ីកាត់របស់





ទ្រង់ និងបណ្ដាណាពីរបស់ទ្រង់ ព្រមទាំងអ្វីៗដែលទ្រង់បង្កើតទាំងមូលជាសក្សីថាពិតប្រាកដណាស់ទ្រង់គឺជាម្ចាស់។គ្មានទេម្ចាស់ផ្សេងដែលត្រូវគេគោរពពិតប្រាកដនោះលើកលែងតែទ្រង់មួយគត់ ហើយប្រាកដណាស់មូហាំម៉ាត់គឺជាអ្នកបំរើរបស់ទ្រង់ និងជាអ្នកនាំសាររបស់ទ្រង់។

**ពេលល្ងាច** ............اَللَّهُمَّ إِنِّي أَمْسَيْتُ (**អល់ឡោះហុំម៉ាអ៊ីនណី អាំសៃតូ.....**)

| នរណាសូត្រវាចំនួន៤ដង អល់ឡោះនឹងដោះលែងគេពីឋាននរក | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក៤ដង ល្ងាច៤ដង | ចំនួននិងពេលវេលា |
|---|---|---|---|

| | |
|---|---|
| ១២ | اللَّهُمَّ عَالِمَ الغَيْبِ والشَّهَادَةِ، فَاطِرَ السَّماوَاتِ والأَرْضِ، رَبَّ كُلِّ شَيءٍ ومَلِيْكَهُ، أَشْهَدُ أَنْ لا إِلَهَ إِلاَّ أَنْتَ، أَعُوذُ بِكَ مِنْ شَرِّ نَفْسِي، وَمِنْ شَرِّ الشَّيْطَانِ وَشِرْكِهِ، وأَنْ أَقْتَرِفَ عَلَى نَفْسِي سُوءاً، أَوْ أَجُرَّهُ إِلَى مُسْلِمٍ |

**(អល់ឡោះហុំម៉ា ហ្វាតីរ៉ស់សើម៉ាវ៉ាតី វ៉ាលអោរឌី អាលីម៉ាលហ្គយពី វ៉ាស្ហស្ហាហើទះ រ៉ប់ពើគុលលីស្ហៃអ៊ីន វ៉ាម៉ាលីកើហូ អាស្ហហើទូអាន់ឡើអ៊ីឡើហើអ៊ីលលើអាន់តា អាអ៊ូហ្សពីកើមិនស្ហើររីណាហ្វស៊ី វ៉ាមិនស្ហើររីស្ហៃតន វ៉ាស៊្ហីរគីហ៊ី វ៉ាអាន់អុកតារីហ្វា អាឡើណាហ្វស៊ីសូអា អៅអាជើររ៉ាហូអ៊ីឡើមូស្លឹម)** មានន័យថា៖ឱអល់ឡោះជាម្ចាស់!ទ្រង់ជាអ្នកបង្កើតប្រាំពីរជាន់មេឃ និងប្រាំពីរជាន់ដី ហើយទ្រង់តែមួយគត់ដែលដឹងពីប្រការអាថ៌កំបាំង និងប្រការដែលលេចធ្លោឡើង ហើយទ្រង់ជាម្ចាស់រាល់អ្វីៗទាំងអស់ ព្រមទាំងជាអ្នកគ្រប់គ្រងអ្វីៗទាំងអស់នោះផងដែរ។ខ្ញុំសូមធ្វើសាក្សីថាពិតប្រាកដណាស់គ្មានទេម្ចាស់ដែលត្រូវគោរពដ៏ពិតប្រាកដគឺមានតែអល់ឡោះមួយគត់។ខ្ញុំសូមទ្រង់បញ្ចៀសរូបខ្ញុំពីអុះពើអាក្រក់របស់ខ្ញុំផ្ទាល់ និងអំពើអាក្រក់របស់ស្ហៃតន ព្រមទាំងអំពើរពហុទេពនិយមរបស់វា ការប្រព្រឹត្តរបស់ខ្ញុំនូវអំពើអាក្រក់លើខ្លួនខ្ញុំផ្ទាល់ ឬក៏អំពើអាក្រក់ទាំងនេះដែលបានបញ្ជូនទៅអ្នកមូស្លឹមផ្សេងទៀត។

| ការពារពីការរំខានរបស់ស្ហៃតួន | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក១ដង ល្ងាច១ដង និងនៅពេលចូលដេក | ចំនួននិងពេលវេលា |
|---|---|---|---|

| | |
|---|---|
| ១៣ | اللَّهُمَّ إِنِّي أَعُوذُ بِكَ مِنَ الهَمِّ والحَزَنِ، والعَجْزِ والكَسَلِ، والبُخْلِ والجُبْنِ، وضَلَعِ الدَّيْنِ وغَلَبَةِ الرِّجَالِ |

**(អល់ឡោះហុំម៉ាអ៊ីនណី អាអ៊ូហ្សពីកើមីណាល់ហាំមុី វ៉ាលហាហ្សាន់ វ៉ាអាអ៊ូហ្សពីកើមីណាល់អាជហ្សី វ៉ាលកើសិល វ៉ាអាអ៊ូហ្សពីកើមីណាល់ជុបណី វ៉ាលពុខល៍ វ៉ាអាអ៊ូហ្សពីកើមីនហ្គរឡើពើតីទទៃណី វ៉ាកោះរីររីជើល)** មានន័យថា៖ឱអល់ឡោះជាម្ចាស់! ខ្ញុំសុំពីទ្រង់បញ្ចៀសរូបខ្ញុំពីទុក្ខកង្វល់ផ្សេងៗ ការទន់ខ្សោយ ការខ្ជិលច្រអូស ការកំណាញ់ ការកំសាក បំណុលច្រើនលើសលប់ និងការសង្កត់សង្កិនរបស់មនុស្ស។

| បំបាត់ទុក្ខកង្វក់ និងគេសងបំណុលឱ្យ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក១ដង ល្ងាច១ដង | ចំនួននិងពេលវេលា |
|---|---|---|---|




| | |
|---|---|
| ១៤ | اللَّهُمَّ أَنْتَ رَبِّي لا إِلَهَ إِلاَّ أَنْتَ، خَلَقْتَنِي وأَنَا عَبْدُكَ، وأَنا عَلَى عَهْدِكَ وَوَعْدِكَ مَا اسْتَطَعْتُ، أَعُوذُ بِكَ مِنْ شَرِّ مَا صَنَعْتُ، أَبُوْءُ لَكَ بِنِعْمَتِكَ عَلَيَّ، وأَبُوْءُ بِذَنْبِي فَاغْفِر لِي فَإِنَّه لا يَغْفِرُ الذُّنُوبَ إِلاَّ أَنْتَ |

(អល់ឡោះហុំម៉ាអាន់តារ៉ប់ពី ឡើអ៊ីឡើហើអ៊ីលឡើអាន់តា ខឡ្លកតាណី វ៉ាអាណាអាប់ទុកើ វ៉ាអាណាអាឡើអះទីកើ វ៉ាវ៉ាក់ទីកើម៉ាសតាតក់តូ អាអ៊ូហ្សូពីកើមីនស្ញើរីម៉ាសរណាក់តូ អាពូអូឡើកើ ពីណិកម៉ាតីកើអាឡៃយ៉ា វ៉ាអាពូអូពីហ្សាមពី ហ្វោគហ្វីរលី ហ្វាអ៊ីនណាហូឡើយ៉ោគហ្វីរ៉ុសហ្សូណូពើអ៊ីលឡើអាន់តា) មានន័យថា៖ឱអល់ឡោះជាម្ចាស់!ទ្រង់ជាម្ចាស់របស់ខ្ញុំគ្មានម្ចាស់ណាដែលរូបខ្ញុំត្រូវគោរពក្រៅពីទ្រង់ឡើយ ទ្រង់បង្កើតរូបខ្ញុំ និងរូបខ្ញុំជាអ្នកបំរើរបស់ទ្រង់ រូបខ្ញុំសូមធ្វើតាមកិច្ចសន្យារបស់ទ្រង់ទៅតាមលទ្ធភាពរបស់ខ្ញុំ។ខ្ញុំសូមពីទ្រង់បញ្ចៀសរូបខ្ញុំអំពីប្រការដែលខ្ញុំបានធ្វើអាក្រក់។រូបខ្ញុំទទួលស្គាល់ហើយនូវលាភសក្ការៈផ្សេងៗទាំងឡាយរបស់ទ្រង់ដែលបានប្រគល់មកឱ្យរូបខ្ញុំ ហើយរូបខ្ញុំក៏ទទួលស្គាល់នូវទោសកំហុសរបស់ខ្លួនទាំងឡាយដែរ។សូមទ្រង់លើកលែងកំហុសឱ្យខ្ញុំផង គ្មាននរណាម្នាក់ដែលអាចលើកលែងទោសឱ្យរូបខ្ញុំបានទេគឺមានតែទ្រង់មួយគត់។

| នរណាសូត្រវានៅពេលថ្ងៃឬពេលយប់ដោយចិត្តជឿជាក់ បើគេស្លាប់នៅពេលថ្ងៃនោះឬពេលយប់នោះគឺគេស្ថិតក្នុងចំណោមអ្នកដែលបានចូលក្នុងឋានសួគ៌។ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ជាចៅហ្វាយនៃការសុំអភ័យទោស ព្រឹក១ដង ល្ងាច១ដង | ចំនួននិងពេលវេលា |
|---|---|---|---|

| | |
|---|---|
| ១៥ | يَا حَيُّ يَا قَيُّومُ بِرَحْمَتِكَ أَسْتَغِيثُ، أَصْلِحْ لِي شَأْنِي كُلَّهُ، وَلاَ تَكِلْنِي إِلَى نَفْسِي طَرْفَةَ عَيْنٍ |

(យ៉ាហៃយ៉ូ យ៉ាកុយយ៉ូម ពីរ៉ោះម៉ាតីកើ អាសតាហ្គីសូ អោសឡៃហលីស្ហាក់ណីគុលឡើហូ វ៉ាឡើតាគីលណី អ៊ីឡើណាហ្វស៊ីតារហ្វាតាអៃណឹ) មានន័យថា៖ឱម្ចាស់ដែលជីវិតអមត្តៈ ឱម្ចាស់ដែលមិនត្រូវការពឹងពាក់អ្វីសោះ ដោយក្តីមេត្តារបស់ទ្រង់រូបខ្ញុំសូមពីទ្រង់នូវជំនួយ និងសូមជួយកែតម្រូវគ្រប់កិច្ចការទាំងឡាយរបស់ខ្ញុំផងចុះ។សូមទ្រង់កុំបោះបង់រូបខ្ញុំចោល សូម្បីតែមួយពព្រិចភ្នែកក៏ដោយ។

| ណាពីបានផ្តាំហ្វាទីម៉ះឱ្យសូត្រវា | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹកម្តង ល្ងាយម្តង | ចំនួននិងពេលវេលា |
|---|---|---|---|

| | |
|---|---|
| ១៦ | اللَّهُمَّ عَافِنِي فِي بَدَنِي، اللَّهُمَّ عَافِنِي فِي سَمْعِي، اللَّهُمَّ عَافِنِي فِي بَصَرِي، لا إِلَهَ إِلاَّ أَنْتَ، اللَّهُمَّ إِنِّي أَعُوذُ بِكَ مِنَ الكُفْرِ وَالفَقْرِ، وأَعُوذُ بِكَ مِنْ عَذَابِ القَبْرِ، لا إِلَهَ إِلاَّ أَنْتَ |

(អល់ឡោះហុំម៉ាអាហ្វីណី ហ្វីពើតេីណី អល់ឡោះហុំម៉ាអាហ្វីណីហ្វីសាំអ៊ី អល់ឡោះហុំម៉ាអាហ្វីណីហ្វីពើសរី អល់ឡោះហុំម៉ាអ៊ីនណីអាអ៊ូហ្សូពីកើមីណាល់គុហ្វរី វ៉ាលហ្វោករី វ៉ាអាអ៊ូហ្សូពីកើមីនអាហ្សើពីលកប់រី ឡើអ៊ីឡើហើអ៊ីលឡើអាន់តា) មានន័យថា៖ឱអល់ឡោះសូមមេត្តាថែរក្សា និងព្យាបាលសរីរាង្គកាយរបស់ខ្ញុំ។ឱអល់ឡោះសូមមេត្តាថែរក្សាការលឺ និងការឃើញរបស់ខ្ញុំ។គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដ គឺមានតែអល់



ឡោះមួយគត់។ឱអល់ឡោះជាម្ចាស់!ខ្ញុំសូមពីទ្រង់មេត្តាបញ្ចៀសរូបខ្ញុំពីប្រការការហៀរ និងភាពក្រីក្រ ហើយសូមទ្រង់បញ្ចៀសពីទារុណកម្មក្នុងផ្នូរ។គ្មានទេម្ចាស់ដែលត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដគឺមានតែអល់ឡោះមួយគត់។

| ណាពីបានទូអាវ៉ា | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក៣ដង ល្ងាយ៣ដង | ចំនួននិងពេលវេលា |
|---|---|---|---|

| | |
|---|---|
| ១៧ | اللَّهُمَّ إِنِّى أَسْأَلُكَ الْعَافِيَةَ فِى الدُّنْيَا وَالآخِرَةِ، اللَّهُمَّ إِنِّى أَسْأَلُكَ الْعَفْوَ وَالْعَافِيَةَ فِى دِينِى وَدُنْيَايَ وَأَهْلِى وَمَالِى، اللَّهُمَّ استُرْ عَوْرَاتِى، وآمِنْ رَوْعَاتِى، اللَّهمَّ احْفَظْنِى مِنْ بَينِ يَدَيَّ، ومِنْ خَلْفِى، وَعن يَمينِى، وعن شِمالِى، ومِن فَوْقِي، وأعُوذُ بعَظَمَتِكَ أنْ أُغْتَالَ مِنْ تَحتى |

មានន័យថា៖ឱអល់ឡោះជាម្ចាស់ពិតប្រាកដណាស់ ខ្ញុំសុំពីទ្រង់នូវសេចក្ដីសណ្ដោសប្រណីនិងសុខសាន្តនៅក្នុងលោកិយ៍នេះ និងនៅថ្ងៃបរលោក។ឱអល់ឡោះជាម្ចាស់ពិតប្រាកដណាស់ ខ្ញុំសុំពីទ្រង់នូវសេចក្ដីសណ្ដោសប្រណីនិងសុខសាន្តនៅក្នុងសាសនារបស់ខ្ញុំ ក្នុងលោកិយ៍របស់ខ្ញុំ ក្រុមគ្រួសារ បងប្អូន ព្រមទាំងទ្រព្យសម្បត្តិរបស់ខ្ញុំផង។ ឱអល់ឡោះជាម្ចាស់សូមទ្រង់ជួយបិតបាំងសរីរាង្គកាយរបស់ខ្ញុំ ហើយសូមផ្ដល់សុវត្ថិភាពឱ្យខ្ញុំផុតពីភាពភ័យខ្លាច។ ឱអល់ឡោះជាម្ចាស់សូមជួយថែរក្សាការពារខ្លួនរបស់ខ្ញុំនៅពីខាងក្រោយខ្ញុំ ពីខាងស្ដាំខ្ញុំ ពីខាងឆ្វេងខ្ញុំ និងពីខាងលើខ្ញុំ ព្រមទាំងសូមបញ្ចៀសខ្លួនខ្ញុំតាមរយៈភាពធំធេងរបស់ទ្រង់អំពីការប៉ុនប៉ងលួចប្រហារមកលើរូបខ្ញុំនៅពីខាងក្រោយខ្ញុំ។

| ណាពីមិនដែលបោះបង់ទូអានេះទេរាល់ពេលព្រឹកនិងពេលរសៀល | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក និងល្ងាច | ចំនួននិងពេលវេលា |
|---|---|---|---|

| | |
|---|---|
| ១៨ | سُبْحَانَ اللهِ وَ بِحَمْدِهِ عَدَدَ خَلْقِهِ ،وَرِضَا نَفْسِهِ وَزِنَةَ عَرْشِهِ وَمِدَادَ كَلِمَاتِهِ |

(ស៊ុបហាណល់ឡោះហ៊ីវ៉ាពីហាំទីហ៊ី អាទើទើខល់គីហ៊ី វ៉ារីឌរណហ្វស៊ីហ៊ី វ៉ាហ្ស៊ីណាតាអារស៊្មីហ៊ី វ៉ាមីទើទើកើលីម៉ាតិះ) មានន័យថា៖អល់ឡោះដ៏ជ្រះស្អាត និងការសរសើរចំពោះទ្រង់ ដូចជាបរិមាណនៃអ្វីៗគ្រប់យ៉ាងដែលជាការបង្កើតរបស់ទ្រង់ ការអធ្យាស្រ័យផ្ទាល់របស់ទ្រង់ និងទម្ងន់អារ៉ស្សរបស់ទ្រង់ ព្រមទាំងបន្ទូលដ៏ច្រើនមហិមារបស់ទ្រង់។

| ល្អប្រសើជាងការហ្សិកៀរពីព្រឹករហូតដល់ថ្ងៃត្រង់ | ឥទ្ធិពលនិងអត្ថប្រយោជន៍ | ព្រឹក៣ដង | ចំនួននិងពេលវេលា |
|---|---|---|---|





# សំដី និងអំពើល្អដែលមានរីវ៉ាយ៉ាត់ប្រាប់ថាទទួលបានផលបុណ្យធំ

| ល.រ | ពាក្យសម្ដីឬកាយវិការដែលល្អប្រសើរ | ផលបុណ្យរបស់វាមានស៊ុណ្ណះបញ្ជាក់។ ណាពីបានមានប្រសាសន៍ថា : |
|---|---|---|
| ១ | لَا إِلَهَ إِلَّا اللهُ وَحْدَهُ لَا شَرِيْكَ لَهُ، لَهُ الْمُلْكُ وَلَهُ الْحَمْدُ، وَهُوَ عَلَى كُلِّ شَيْءٍ قَدِيْرٍ (ឡាអ៊ីឡាហើអ៊ីលលល់ឡោះហ្វាះទើហូ ឡាស៊ើរីកើឡុះ ឡើហ៊ូលមុលគូវ៉ាឡើហ៊ូលហាំទូ វ៉ាហ៊្វាអាឡើគុលលីស្ហៃអ៊ីនកទៀរ) មានន័យថា៖គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែអល់ឡោះមួយគត់ គ្មានស្ហីរិកនឹងទ្រង់ឡើយ។ ការគ្រប់គ្រង និងការសរសើរទាំងឡាយសម្រាប់អល់ឡោះ។អល់ឡោះជាម្ចាស់ខ្លាំងពូកែលើសអ្វីៗទាំងអស់។ | «នរណាបានសូត្រ «لا إله إلا الله وحده لاشريك له له الملك وله الحمد وهو على كل شيء قدير» ក្នុង១ថ្ងៃចំនួន១០០ដងស្មើនឹងគេលោះខ្ញុំបម្រើជប់នាក់។ គេឱ្យផលបុណ្យចំនួន១០០ គេលុបអំពើបាបចំនួន១០០ ហើយនៅថ្ងៃនោះគេជៀសផុតពីស្ហៃតនរហូតដល់ពេលល្ងាច។ គ្មាននរណាម្នាក់ធ្វើបានប្រសើរជាងនេះ លើកលែងតែអ្នកនោះធ្វើបានច្រើនជាងនេះ»។ |
| ២ | سُبْحَانَ اللهِ الْعَظِيْمِ وَبِحَمْدِهِ (ស៊ុបហាណល់ឡោះហ៊ីលអាហ្ស៊ីម វ៉ាពីហាំទីហ៊ី) មានន័យថា៖អល់ឡោះជាម្ចាស់ដ៏មហាស្អាតស្អំបំផុត និងការសរសើរចំពោះទ្រង់។ | «នរណាបានសូត្រ «سُبْحَانَ اللهِ الْعَظِيْمِ وَبِحَمْدِهِ» គឺគេដាំដើមល្មើឱ្យអ្នកនោះមួយដើមនៅក្នុងឋានសួគ៌» |
| ៣ | سُبْحَانَ اللهِ وَبِحَمْدِهِ سُبْحَانَ اللهِ الْعَظِيْمِ (ស៊ុបហាណល់ឡោះហ៊ីវ៉ាពីហាំទីហ៊ី វ៉ាស៊ុបហាណល់ឡោះហ៊ីវ៉ាពីហាំទីហ៊ី ស៊ុបហាណល់ឡោះហ៊ីលអាហ្ស៊ីម) មានន័យថា៖អល់ឡោះដ៏ជ្រះស្អាត និងការសរសើរចំពោះទ្រង់។អល់ឡោះដ៏ជ្រះស្អាត និងការសរសើរចំពោះទ្រង់។អល់ឡោះជាម្ចាស់ដ៏មហាស្អាតស្អំបំផុត។ | «នរណាបានសូត្រ«سُبْحَانَ اللهِ وَبِحَمْدِهِ» ចំនួន១០០ដង នៅពេលព្រឹកនិងពេលល្ងាច នោះគេលុបអំពើបាបរបស់អ្នកនោះ ទោះបីជាដូចពពុះសមុទ្រក៏ដោយ។ នៅថ្ងៃគីយ៉ាម៉ាត់គ្មាននរណាម្នាក់នាំមកនូវអ្វីដែលល្អប្រសើរជាងអ្វីដែលគេបាននាំមក លើកលែងអ្នកដែលបានសូត្រដូចអ្វីដែលគេបានសូត្រ ឬសូត្រច្រើនជាងនោះ»។ «មានពាក្យពីរម៉ាត់ស្រាលលើអណ្ដាត និងធ្ងន់នៅលើជញ្ជីង ហើយអល់ឡោះទ្រង់ពេញចិត្តគឺ «سُبْحَانَ اللهِ الْعَظِيْمِ، سُبْحَانَ اللهِ وَبِحَمْدِهِ» |
| ៤ | لَا حَوْلَ وَلَا قُوَّةَ إِلَّا بِاللهِ (ឡាហៅឡើវ៉ាឡាគូវ៉ាតាអ៊ីលឡាពិលឡើហ៍) មានន័យថា៖គ្មានកំលាំង និងអំណាចអ្វីមួយដែលពូកែឡើយ គឺមាន | «តើអ្នកចង់ឱ្យខ្ញុំប្រាប់ពីកំណប់មួយនៃកំណប់ទាំងឡាយនៅក្នុងឋានសួគ៌ទេ? ខ្ញុំបានឆ្លើយថា បាទចង់។ ណាពីបានមានប្រសាសន៍ថា |

| | | |
|---|---|---|
| | តែអល់ឡោះមួយគត់។ | «لاَ حَوْلَ وَلاَ قُوَّةَ إِلَّا بِاللهِ » |
| ៥ | ទូអាសុំចូលឋានសួគ៌ និងបញ្ចៀសពីនរក | ជនណាដែលបាសុំពីអល់ឡោះអោយគាត់បានចូលឋានសួគ៌ចំនួនបីដង ឋានសួគ៌បាននិយាយ ឱអល់ឡោះជាម្ចាស់សុំបញ្ចូលគាត់ក្នុងឋានសួគ៌ផងចុះ។ ហើយជនណាដែលបានសុំបញ្ចៀសពីឋាននរកបីដង ឋាននរកបាននិយាយថា ឱអល់ឡោះជាម្ចាស់សុំបញ្ចៀសគាត់ពីឋាននរកផងចុះ។ |
| ៦ | ទូអាបញ្ចប់កម្មវិធី | «នរណាបានអង្គុយនៅក្នុងកម្មវិធី ហើយនៅក្នុងកម្មវិធីនោះមានសំឡេងអ៊ូអរ ហើយគេបានសូត្រមុននឹងគេក្រោកចេញពីកម្មវិធីរបស់គេថា«سُبْحَانَكَ اللَّهُمَّ وَبِحَمْدِكَ أَشْهَدُ أَنْ لاَ إِلَهَ إِلَّا أَنْتَ أَسْتَغْفِرُكَ وَأَتُوبُ إِلَيْكَ» (ស៊ុបហាណាកល់ឡោះហ៊ុំម៉ាវ៉ាពីហាំទីកេី អាស្ហហើទូអាន់ឡេីអ៊ីឡេីហេីអ៊ីលឡេីអាន់តា អាសតោគហ្វីរ៉ូកេី វ៉ាអាតូពូអ៊ីឡៃក៏) មានន័យថា៖ទ្រង់ដ៏មហាបរិសុទ្ធ ឱអល់ឡោះម្ចាស់របស់ខ្ញុំ និងដោយក្តីសរសើរចំពោះទ្រង់។ ខ្ញុំសូមធ្វើសាក្សីថាគ្មានទេម្ចាស់ ដែលពិតប្រាកដផ្សេងពីទ្រង់។ ខ្ញុំសូមអភ័យទោសពីទ្រង់ និងសូមសារភាពកំហុសចំពោះទ្រង់។ នោះគេអភ័យទោសឱ្យនូវអ្វីដែលបានកើតឡើងនៅក្នុងកម្មវិធីនោះ»។ |
| ៧ | អ្នកដែលទន្ទេញអាយ៉ាត់មួយចំនួននៃសូរ៉ោះកះហ្វី | «នរណាបានទន្ទេញចាំ១០អាយ៉ាត់ដំបូងនៃសូរ៉ោះកះហ្វីគឺត្រូវបានគេការពារពីទ័ជ្ជាល»។ |
| ៨ | សឡាវ៉ាតទៅលើណាពី | «នរណាសឡាវ៉ាតទៅលើណាពីម្តងនោះអល់ឡោះសឡាវ៉ាតចំពោះគេដប់ដង និងជម្រះអំពើបាបរបស់គេចំនួន១០និងលើកឋានៈគេ១០កម្រិត»ក្នុងរីវ៉ាយ៉ាត់មួយទៀតថា«គេកត់ផលបុណ្យឱ្យចំនួន១០»។ |
| ៩ | អត្ថប្រយោជន៍នៃការសូត្រអាយ៉ាត់ខ្លះនៅក្នុងគួរអាន | «នរណាបានសូត្រអាល់គួរអានក្នុងមួយថ្ងៃមួយយប់ចំនួន៥០អាយ៉ាត់ នោះគេមិនកត់ឈ្មោះអ្នកនោះក្នុងបញ្ជីពួកអ្នកដែលភ្លេចភ្លាំង។ នរណាបានសូត្រចំនួន១០០អាយ៉ាត់ គឺគេ កត់ឈ្មោះរបស់អ្នកនោះក្នុងបញ្ជីពួកអ្នកដែលគោរពប្រណិប័តន៍។ នរណាបានសូត្រចំនួន២០០អាយ៉ាត់គឺអាល់គួរអានមិនតវ៉ាប្រឆាំងជាមួយនឹងអ្នកនោះឡើយ។ នរណាបានសូត្រ៥០០អាយ៉ាត់គឺនឹងទទួលបានផលបុណ្យមួយកិនតើរ(قِنْطَار)»<br>«នរណាបានសូត្រសូរ៉ោះអៀខឡើស«قل هو الله أحد» ស្មើនឹងមួយភាគបីនៃអាល់គួរអាន។ |
| ១០ | ផលបុណ្យសម្រាប់អ្នក | «ជាការពិតណាស់គ្មានអ្វីឮសម្លេងអ្នកអាហ្សាន ទោះជិនឬមនុស្ស ឬគ្មានអ្វីមួយ លើកលែងតែជាសាក្សីសម្រាប់ |

| | | |
|---|---|---|
| | អាហ្សាន | អ្នកអាហ្សាននោះនៅថ្ងៃអាឃីរ៉ាត់» «អ្នកអាហ្សានមានករវែង(ជាសញ្ញាសម្គាល់)នៅថ្ងៃគីយ៉ាម៉ាត់» |
| ១១ | ថាតាមអ្នកអាហ្សាន | «នរណាបានសូត្រនៅពេលឮអាហ្សានរួចថា៖ «اَللَّهُمَّ رَبَّ هَذِهِ الدَّعْوَةِ التَّامَّةِ وَالصَّلَاةِ الْقَائِمَةِ آتِ مُحَمَّدًا الْوَسِيْلَةَ وَالْفَضِيْلَةَ وَابْعَثْهُ مَقَامًا مَحْمُوْدًا الَّذِيْ وَعَدْتَهُ» (អល់ឡោះហ៊ុំម៉ារ៉ប់ពើហើស៊ីហ៊ីទតាក់វ៉ាតិតតាមម៉ះ វ៉ាសស្វលាទីលកអ៊ីម៉ះ អាតីមូហាំម៉ាទើណិលវ៉ាស៊ីឡើតាវ៉ាលហ្វាឌីឡះ វ៉ាបអាស់ហ៊ូលម៉ាក៏មុាំម៉ះម៉ូទើណិលឡើហ្សីវ៉ាអាទតះ) មានន័យថា៖ឱអល់ឡោះជាម្ចាស់នៃការអំពាវនាវដ៏សក្តិសិទ្ធឥតខ្ចោះ និងជាម្ចាស់នៃការសឡាហ៍ដែលគេបានបញ្ឈរឡើង។សូមទ្រង់ផ្តល់ដល់ម៉ូហាំម៉ាត់នូវកន្លែងដ៏ល្អ(នៅក្នុងឋានសួគ៌)និងឋានៈដ៏ខ្ពង់ខ្ពស់ផងចុះ។សូមបញ្ជូនម៉ូហាំម៉ាត់ទៅកន្លែងដ៏អស្ចារ្យដែលគេកោតសរសើរតាមការដែលទ្រង់ធ្លាប់បានសន្យាផ្តល់ដល់ម៉ូហាំម៉ាត់នោះ។ប្រាកដណាស់ទ្រង់មិនដែលក្បត់ពាក្យសន្យាឡើយ។ **គេនឹងទទួលបានការសហ្វាអាត់ពីខ្ញុំនៅថ្ងៃគីយ៉ាម៉ាត់»** |
| ១២ | យកទឹកវុហ្ហូឱ្យផ្ចិតផ្ចង់ | «នរណាបានយកទឹកវូហ្ហូបានល្អគ្រប់លក្ខណៈ នោះអំពើបាបរបស់គេនឹងជ្រុះពីខ្លួនរបស់គេរហូតដល់ចេញពីក្រោមក្រចករបស់គេ» |
| ១៣ | ទូអាបន្ទាប់ពីយកទឹកវូហ្ហូ | «គ្មានអ្នកមុស្លីមណាម្នាក់យកទឹកវូហ្ហូបានល្អគ្រប់លក្ខណៈ ក្រោយមកគេសូត្រ៖ «أَشْهَدُ أَنْ لَا إِلَهَ إِلَّا اللهُ وَأَنَّ مُحَمَّدًا عَبْدُ اللهِ وَرَسُوْلُهُ» (អាស្ហហើទូអាន់ឡើអ៊ីឡើហើអ៊ីលលល់ឡោះ វ៉ាអាន់ណាម៉ូហាំម៉ាទ័នអាប់ទូហូវ៉ារ៉ស៊ូលុះ) មានន័យថា៖ខ្ញុំសុំធ្វើសាក្សីថាគ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែអល់ឡោះ ហើយពិតណាស់ម៉ូហាំម៉ាត់ជាខ្ញុំបំរើរបស់អល់ឡោះ និងជាអ្នកនាំសាររបស់ទ្រង់។ **លើកលែងតែទ្រង់បើកទ្វាឋានសួគ៌ទាំងប្រាំបីឱ្យគេចូលតាមទ្វាណាដែលគេចង់ចូល»**។ |
| ១៤ | សឡាតពីររ៉ាកអាត់បន្ទាប់ពីយកទឹកវូហ្ហូរួច | «គ្មានអ្នកមូស្លីមណាម្នាក់យកទឹកវូហ្ហូបានល្អគ្រប់លក្ខណៈ ក្រោយមកគេសឡាតពីររ៉ាកអាត់ ដោយដួងចិត្តនិងអារម្មណ៍របស់គេផ្តោតក្នុងសឡាតនោះ លើកលែងតែគេត្រូវបានចូលឋានសួគ៌»។ |
| ១៥ | ដើរទៅកាន់ម៉ាស្ជិតឱ្យបានច្រើនជំហាន | «នរណាបានដើរទៅម៉ាស្ជិតនៅពេលល្ងាចដើម្បីសឡាតជាម៉ាអះ នោះមួយជំហានរបស់គេត្រូវបានគេសម្អាតពីអំពើបាបមួយ និង បានអំពើល្អមួយ ទាំងទៅទាំងមក»។ |

| | | |
|---|---|---|
| ១៦ | រៀបចំខ្លួនទៅសឡាតជុំអាត់ឱ្យបានមុនគេ | «នរណាបានមុជទឹកនៅថ្ងៃជុំអាត់និងដើរទៅពីព្រឹក ហើយគេមិនបានជិះយានជំនិះទេ រួចគេបានទៅអង្គុយជួរមុខជិតអ៊ីម៉ាំ ហើយស្តាប់និងមិនលេងសើច នោះរាល់ជំហានដែលគេបានដើរទៅនោះទទួលបានផលបុណ្យប្រៀបដូចជាការធ្វើអ៊ីហ្គាហ្វាត់មួយឆ្នាំគិតទាំងផលបុណ្យនៃការបួសនិងក្រោកឈរសឡាតពេលយប់»។ «បុរសគ្រប់រូបដែលបានងូតទឹកនៅថ្ងៃជុំអាត់ យករូហ្វតាមលទ្ធភាព លាបប្រេង ឬប្រើគ្រឿងក្រអូបពីផ្ទះរបស់គេ បន្ទាប់មកគេចេញទៅសឡាត ដោយមិនដើកយកកន្លែងរវាងមនុស្សពីរនាក់ (ដើរកន្លងគេ) ហើយសឡាតនូវអ្វីដែលគេបង្គាប់ឱ្យសឡាត ព្រមទាំងបាននៅស្ងៀមនៅពេលអ៊ីម៉ាំសូត្រឃុតហ្ពះ អល់ឡោះនឹងអភ័យទោសឱ្យគេពីចន្លោះជំអាត់ទៅជុំអាត់មួយទៀត»។ |
| ១៧ | ទាន់តឹកពៀរ៉តុលអៀសរ៉ម | «នរណាបានសឡាតចាម៉ាអះដោយចិត្តស្មោះសរ ទាន់តឹកពៀរ៉តុលអៀសរ៉មចំនួន៤០ថ្ងៃ នោះគេបានរួចផុតពីពីរប្រការគឺរួចផុតពីភ្លើងនរក និងរួចផុតពីមូណាហ្វិក» |
| ១៨ | សឡាតហ្វារហ្វូចាម៉ាអះ | «សឡាតចាម៉ាអះល្អជាងសឡាតម្នាក់ឯង២៧កម្រិត»។ |
| ១៩ | អ្នកសឡាតអ៊ីស្សានិងសូហ្វោះចាម៉ាអះ | «នរណាបានសឡាតអ៊ីស្សាចាម៉ាអះប្រៀបបីដូចជាគេសឡាតពាក់កណ្តាលយប់ហើយនរណាសឡាតសូហ្វោះចាម៉ាអះប្រៀបបីដូចជាគេសឡាតពេញមួយយប់»។ |
| ២០ | សឡាតនៅជួរទីមួយ | «បើសិនជាមនុស្សដឹងពីផលបុណ្យនៃការអាហ្សាននិងការសឡាតនៅជួរទីមួយ ហើយពួកគេគ្មានមធ្យោបាយអ្វីដើម្បីទទួលបានដូច្នោះក្រៅពីការចាប់ឆ្នោត នោះពួកគេនឹងដណ្តើមគ្នាចាប់ឆ្នោត»។ |
| ២១ | សឡាតស៊ូណាត់ឱ្យបានច្រើន | «អ្នកត្រូវស៊ូជោតឱ្យបានច្រើន ពីព្រោះថា គ្មានទេការស៊ូជោតរបស់អ្នកចំពោះអល់ឡោះចំនួនមួយដង លើកលែងតែអល់ឡោះលើកឋានៈឱ្យអ្នកមួយកម្រិត និងជម្រុះអំពើបាបរបស់អ្នកចំនួនមួយតាមរយៈការស៊ូជោត»។ |
| ២២ | អ្នកដែលថែរក្សាសូណាត់ រ៉ាតិប | «នរណាបានសឡាតមួយថ្ងៃមួយយប់ចំនួន១២រ៉ក់អាត់គឺអល់ឡោះសង់ផ្ទះឱ្យគេមួយនៅក្នុងឋានសួគ៌។ បួនរ៉កអាត់មុនហ្សូហ្វូរ និងពីររ៉ក់អាតបន្ទាប់ពីហ្សូហ្វូរ ហើយពីររ៉ក់អាត់ក្រោយមោគ្រិប និងពីររ៉ក់អាត់ក្រោយអ៊ីស្សានិងពីររ៉ក់អាត់មុនសូហ្វោះ» |
| ២៣ | រ៉ាតិបមុនសូហ្វោះនិងសឡាតសូ | «ពីររ៉ក់អាត់មុនសូហ្វោះល្អជាងលោកីយ៍និងអ្វីៗដែលមាននៅក្នុងលោកីយ៍»។ «នរណាបានសឡាតសូហ្វោះគឺ |





| | | |
|---|---|---|
| | ហ្ហោះ | គេស្ថិតក្រោមការថែរក្សាពីអល់ឡោះជាម្ចាស់»។ |
| ២៤ | សឡាតឌូហា | «ជារៀងរាល់ព្រឹក គ្រប់សន្លាក់របស់ពួកអ្នកត្រូវធ្វើសហ្ទាកោះឱ្យវា រាល់ការតើសប៊្ហៀសគឺសហ្ទាកោះ រាល់ការតះមីតគឺសហ្ទាកោះ រាល់ការតះលីលគឺសហ្ទាកោះ រាល់ការតើកព្បៀរគឺសហ្ទាកោះ ប្រើគ្នាឱ្យធ្វើអំពើល្អគឺសហ្ទាកោះ ហាមឃាត់ពីប្រការអាក្រក់គឺសហ្ទាកោះ ហើយតបស្នងទៅលើប្រការទាំងនោះដោយការសឡាតឌូហាពីររ៉ើកអាត់» |
| ២៥ | អ្នកដែលអង្វរហ្សីកៀរចំពោះអល់ឡោះនៅកន្លែងសឡាតរបស់គេ | «ពួកទេវតាឱ្យពរជ័យចំពោះនរណាម្នាក់ក្នុងចំណោមពួកអ្នកដែលនៅកន្លែងសឡាតរបស់គេ និងមានទឹកវូហ្ទ ដោយទូអាថា<br>(អល់ឡោះហុំម៉ាគហ្វិរឡើហ្ទ អល់ឡោះហុំម៉ារហាំហ្ទ)<br>មានន័យថា៖ ឱអល់ឡោះជាម្ចាស់! សូមទ្រង់អភ័យទោសដល់គាត់ និងសណ្ដោសប្រណីដល់គាត់ផង។ |
| ២៦ | ហ្សីកៀរចំពោះអល់ឡោះបន្ទាប់ពីសឡាតចាម៉ាអះសូហ្ហោះរហូតដល់ថ្ងៃរះក្រោយមកសឡាតពីររ៉ើកអាត់ | «អ្នកណាបានសឡាតសូហ្ហោះជាចាម៉ាអះ រួចហើយគេអង្គុយហ្សីកៀរចំពោះអល់ឡោះរហូតដល់ថ្ងៃរះ បន្ទាប់មកសឡាតពីររ៉ើកអាត់ នោះផលបុណ្យរបស់គេហាក់បីដូចជាផលបុណ្យនៃការធ្វើហាជ្ជីនិងអុំរ៉ោះ ពេញ លេញ មិនខ្វះបន្តិចសោះឡើយ»។ |
| ២៧ | អ្នកដែលក្រោកសឡាតពេលយប់និងដាស់ប្រពន្ធរបស់គេ | «អ្នកណាបានក្រោកនៅពេលយប់ ហើយគេបានដាស់ប្រពន្ធរបស់គេ រួចគេទាំងពីរសឡាតពីររ៉ើកអាត់ នោះអល់ឡោះនឹងកត់ត្រាគេក្នុងចំណោមពួកអ្នកដែលហ្សីកៀរច្រើនចំពោះអល់ឡោះ ទាំងបុរសនិងស្ត្រី»។ |
| ២៨ | អ្នកដែលមានបំណងចង់សឡាតពេលយប់តែដេកជ្រុល | «គ្មានអ្នកឥស្លាមណាម្នាក់ដែលមានបំណងចង់សឡាតពេលយប់ តែគេដេកជ្រុល លើកលែងតែអល់ឡោះសរសេរផលបុណ្យសឡាតរបស់គេ ហើយការដេករបស់គេនោះជាសហ្ទាកោះ» |
| ២៩ | សូត្រ «سُبْحَانَ اللهِ وَالْحَمْدُ لِلَّهِ وَاللهُ أَكْبَرُ» ចំនួន៣៣ដងហើយបញ្ចប់ដោយ «لا إله إلا الله ......» នៅខាងក្រោយ | «អ្នកណាបានសូត្រក្រោយពីសឡាតរួច سُبْحَانَ اللهِ ចំនួន៣៣ដង الْحَمْدُ لِلَّهِ ចំនួន៣៣ដង اللهُ أَكْبَرُ ចំនួន៣៣ដង ទាំងនោះស្មើនឹង៩៩ រួចថាបង្គ្រប់ចំនួន១០០ថា៖<br>«لَا إِلَهَ إِلَّا اللهُ وَحْدَهُ لَا شَرِيْكَ لَهُ، لَهُ الْمُلْكُ وَلَهُ الْحَمْدُ وَهُوَ عَلَى كُلِّ شَيْءٍ قَدِيْرٌ»<br>(ឡាអ៊ីឡាហើអ៊ីលលល់ឡោះហ្វះទើហ្ទឡាស្ទើរីកើឡះ ឡើហ្ទលមុលគូវ៉ាឡើហ្ទលហាំទូ វ៉ាហ្វាអាឡើគុលលីស្ទែអ៊ីនកឌីរ) មានន័យថា៖គ្មានទេម្ចាស់ដែលត្រូវគេគោរពដ៏ពិតប្រាកដគឺមានតែអល់ឡោះមួយគត់ គ្មានស្ហ៊ីរិកនឹងទ្រង់ |

| | | |
|---|---|---|
| | សឡាតហ្វារហ្វូ | ឡើយ។ការគ្រប់គ្រង និងការសរសើរទាំងឡាយសម្រាប់អល់ឡោះ។អល់ឡោះជាម្ចាស់ខ្លាំងពូកែលើសអ្វីៗទាំងអស់។ ទ្រង់អនុគ្រោះឱ្យកំហុសរបស់គេទោះបីជាដូចពពុះទឹកសមុទ្រក៏ដោយ»។ |
| ៣០ | អ្នកដែលប្រាប់ថ្នាំថ្ងៃអាយីរ៉ាត់ | «បុគ្គលណាប្រាប់ថ្នាំថ្ងៃអាយីរ៉ាត់ អល់ឡោះនឹងធ្វើឱ្យមានភាពស្ងប់ស្ងាមក្នុងដួងចិត្តរបស់គេ ហើយគ្រប់កិច្ចការផ្សេងៗរបស់គេទ្រង់ជួយសម្រួលទៅតាមសាច់រឿងរបស់វា។ ទ្រង់ប្រទានសម្បត្តិលោកីយ៍ឱ្យគេ ដោយសម្បត្តិនេះមិនអស្ចារ្យសម្រាប់រូបគេ»។ |
| ៣១ | សូត្រអាយ៉ាតគួរស៊ីបន្ទាប់ពីសឡាតហ្វារហ្វូ | «នរណាបានសូត្រអាយ៉ាត់គួរស៊ីបន្ទាប់ពីសឡាតហ្វារហ្វូ គ្មានអ្វីឃាំងគេពីឋានសួគ៌ក្រៅពីសេចក្តីស្លាប់»។ |
| ៣២ | ទៅសួរសុខទុក្ខអ្នកជំងឺ | «គ្មានអ្នកឥស្លាមណាម្នាក់ទៅសួរសុខទុក្ខបងប្អូនឥស្លាមមួយពេលព្រឹកលើកលែងតែពួកទេវតាចំនួនប្រាំពីរម៉ឺននាក់បានសុំពរជ័យឱ្យគេរហូតដល់ពេលល្ងាច។ បើគេទៅសួរសុខទុក្ខនៅពេលល្ងាច ពួកទេវតាប្រាំពីរម៉ឺននាក់សុំពរជ័យឱ្យគេរហូតដល់ពេលព្រឹក ហើយគេទទួលបានចម្ការមួយនៅក្នុងឋានសួគ៌»។ |
| ៣៣ | ទូអាពេលឃើញនរណាម្នាក់រងគ្រោះថ្នាក់ | ជនណាហើយដែលបានឃើញនរណាម្នាក់រងគ្រោះថ្នាក់ហើយសូត្រថា (ការសរសើរទាំងឡាយចំពោះអល់ឡោះដែលទ្រង់បានជួយសង្គ្រោះដល់រូបខ្ញុំនូវអ្វីដែលទ្រង់បានសាកល្បងចំពោះវា ហើយទ្រង់បានលើកតម្កើងរូបខ្ញុំជាច្រើនអំពីអ្វីដែលទ្រង់បានបង្កើត។ |
| ៣៤ | រំលែកទុក្ខអ្នករងគ្រោះថ្នាក់ | «នរណាបានជួយរំលែកទុក្ខអ្នករងគ្រោះ គឺគេនឹងទទួលផលបុណ្យដូចអ្នករងគ្រោះថ្នាក់នោះដែរ»។ «គ្មានអ្នកឥស្លាមណាម្នាក់ជួយរំលែកទុក្ខបងប្អូនរបស់គេលើកលែតែអល់ឡោះបំពាក់អាវកិត្តិយសមួយឱ្យគេ»។ |
| ៣៥ | សឡាតម៉ៃយិតនិងហែរម៉ៃយិតទៅកាន់ផ្នូរនិងរង់ចាំរហូតដល់បញ្ចុះសពរួច | «អ្នកណាបានទៅមើលម៉ៃយិតរហូតបានសឡាតម៉ៃយិតគឺគេទទួលបានមួយគីរ៉ត ហើយនរណាបានទៅមើលម៉ៃយិតរហូតដល់បញ្ចុះក្នុងផ្នូរគឺគេទទួលបានពីរគីរ៉ត មានគេសួរថា គីរ៉តជាអ្វី? លោកបានឆ្លើយថា គឺប្រៀបដូចជាភ្នំពីរដ៏ធំ»។ «អ៊ីបនូអូម៉ើរបាននិយាយថា ពួកយើងបានបាត់បង់ឱកាសក្នុងការទទួលបានគីរ៉តជាច្រើន»។ |





| | | |
|---|---|---|
| ៣៦ | អ្នកដែលសាងសង់ម៉ាស្ជិតដើម្បីអល់ឡោះ ឬចូលរួមសាងសង់ | «អ្នកណាបានសាងសង់ម៉ាស្ជិតដើម្បីអល់ឡោះសូម្បីតែតូចប៉ុនសម្បុកបក្សីក៏ដោយគឺអល់ឡោះសង់ផ្ទះឱ្យគេមួយនៅក្នុងឋានសួគ៌»។ |
| ៣៧ | ការបរិច្ចាគ | «គ្មានថ្ងៃណាមួយដែលខ្ញុំបម្រើរបស់ទ្រង់ក្រោកពីដំណេកលើកលែងតែមានទេវតាពីរចុះមក ម្នាក់ក្នុងចំណោមអ្នកទាំងពីរនិយាយថា បពិត្រអល់ឡោះជាម្ចាស់ សូមទ្រង់ប្រទានឱ្យជំនួសវិញចំពោះអ្នកដែលបរិច្ចាគ។ ម្នាក់ទៀតបាននិយាយថា បពិត្រអល់ឡោះជាម្ចាស់សូមទ្រង់ ធ្វើឱ្យវិនាសចំពោះអ្នកដែលរិះកំណាញ់។ |
| ៣៨ | សហ្ទាកោះ | «ការបរិច្ចាគទ្រព្យដើម្បីធ្វើសហ្ទាកោះ ពុំធ្វើឱ្យខាតបង់ទ្រព្យសម្បត្តិនោះទេ ហើយអល់ឡោះទ្រង់គ្មានបន្ថែមអ្វីចំពោះអ្នកដែលចេះអត់ឱនក្រៅពីលើកកិត្តិយសនិងសេចក្តីថ្លៃថ្នូរនោះឡើយ។ គ្មាននរណាម្នាក់ឱនលំទោនដើម្បីអល់ឡោះ លើកលែងតែ ទ្រង់លើកតម្កើងគេ»។ «មួយឌៀរហាំឈ្នះ១០ម៉ឺនឌៀរហាំ។ ពួកគេបានសួរថា បពិត្រអ្នកនាំសារ តើវាកើតឡើងយ៉ាងដូចម្តេច? គាត់បានឆ្លើយថា បុរសម្នាក់មានលុយពីរឌៀរហាំហើយគេបានយកលុយរបស់គេ១ឌៀរហាំទៅធ្វើសហ្ទាកោះ។ រីឯម្នាក់ទៀតមានលុយ និងទ្រព្យសម្បត្តិច្រើន ហើយគេយកទ្រព្យរបស់គេចំនួន១០ម៉ឺនទៅបរិច្ចាគ» |
| ៣៩ | កម្ចីដោយគ្មានការប្រាក់ | «គ្មានអ្នកឥស្លាមណាម្នាក់ដែលឱ្យអ្នកឥស្លាមម្នាក់ទៀតខ្ចីចំនួនពីរដង លើកលែងតែ ដូចជាគេបរិច្ចាគចំនួនមួយដង»។ |
| ៤០ | អធ្យាស្រ័យចំពោះអ្នកដែលមានទុក្ខលំបាក | «មានបុរសម្នាក់ឱ្យមនុស្សជាច្រើនខ្ចីបំណុលគាត់។ គាត់បាននិយាយទៅកាន់ខ្ញុំបម្រើរបស់គាត់ថា បើអ្នកបានទៅជួបអ្នកមានទុក្ខលំបាក ចូរអធ្យាស្រ័យចំពោះគេ សង្ឃឹមថាអល់ឡោះនឹងអធ្យាស្រ័យចំពោះយើង។ លោកបានមានប្រសាសន៍ថា គាត់បានទៅជួបអល់ឡោះ ហើយទ្រង់បានអធ្យាស្រ័យចំពោះគាត់» |
| ៤១ | បួសមួយថ្ងៃដើម្បីអល់ឡោះ | «នរណាបានបួសមួយថ្ងៃដើម្បីអល់ឡោះជាម្ចាស់ គឺទ្រង់នឹងបញ្ចៀសគេពីភ្លើងនរករយៈកាលចិតសិបឆ្នាំ» |
| ៤២ | បួសបីថ្ងៃជារៀងរាល់ខែ.ថ្ងៃអារ៉ាហ្វះ.និងថ្ងៃអាស្ហ៊ូរ៉ា | «បួសបីថ្ងៃជារៀងរាល់ខែនិងពីរ៉ម៉ាហ្ទនមួយទៅកាន់រ៉ម៉ាហ្ទនមួយទៀតគឺជាការបួសពេញមួយឆ្នាំ»។ «មានគេសួរណាពីពីការបួសក្នុងថ្ងៃអារ៉ាហ្វះ។ លោកបានឆ្លើយថា ជម្រុះអំពើបាបមួយឆ្នាំកន្លងនិងឆ្នាំខាងមុខ» «ហើយមាន |

| | | |
|---|---|---|
| | | គេសួរពីការបួសនៅថ្ងៃអាស៊ូរ៉ា លោកបានឆ្លើយថា ជម្រុះអំពើបាបមួយឆ្នាំដែលកន្លងផុត»។ |
| ៤៣ | បួសប្រាំមួយថ្ងៃនៃខែស្សាវ៉ាល់ | «នរណាបានបួសក្នុងខែរ៉ម៉ាឌន ហើយបន្តបួសចំនួនប្រាំមួយថ្ងៃនៃខែស្សាវ៉ាល់ គឺដូចជាគេបួសពេញមួយឆ្នាំ»។ |
| ៤៤ | សឡាតតារ៉ាវីស ជាមួយអ៊ីម៉ាំរហូតដល់ចប់ | «ពិតណាស់បុរស់ម្នាក់នៅពេលគេសឡាតជាមួយអ៊ីមាំរហូតដល់ចប់ គេគិតផលបុណ្យឱ្យដូចក្រោកសឡាតពេញមួយយប់»។ |
| ៤៥ | ធ្វើហាជ្ជីមាប់រួរ (مبرور) | «អ្នកណាបានបំពេញកាតព្វកិច្ចហាជ្ជី ហើយគេមិនបានរួមដំណេក និងមិនបានធ្វើបទល្មើសផ្សេងៗ នោះគេត្រលប់មកវិញហាក់បីដូចជានៅថ្ងៃដែលគេកើតចេញពីផ្ទៃម្តាយរបស់គេ»។ «ហាជ្ជីមាប់រួរគ្មានអ្វីតបស្នងទេលើកលែងតែឋានសួគ៌»។ |
| ៤៦ | ធ្វើអ៊ុំរ៉ោះនៅខែរ៉ម៉ាឌន | «ការធ្វើអ៊ុំរ៉ោះក្នុងខែរ៉ម៉ាឌនស្មើនឹងធ្វើហាជ្ជី ឬធ្វើហាជ្ជីជាមួយខ្ញុំ»។ |
| ៤៧ | ធ្វើអំពើកុសលនៅដប់ថ្ងៃដំបូងនៃខែហ្ស៊ុលហាជ្ជះ | «គ្មានថ្ងៃណាមួយដែលធ្វើអំពើល្អ អល់ឡោះស្រលាញ់ជាងថ្ងៃនេះទេ»គឺ ដប់ថ្ងៃនៃខែហ្ស៊ុលហាជ្ជះ។ ពួកគេបានសួរថា បពិត្រអ្នកនាំសារ សូម្បីតែការតស៊ូក្នុងផ្លូវរបស់អល់ឡោះ? លោកបានឆ្លើយថាសូម្បីតែការតស៊ូក្នុងផ្លូវរបស់អល់ឡោះ លើកលែងតែ បុរសម្នាក់គេបាន ចេញទៅទាំងខ្លួនប្រាណនិងទ្រព្យសម្បត្តិរបស់គេ ហើយគេមិនយកអ្វីត្រលប់មកវិញសោះ»។ |
| ៤៨ | ផលបុណ្យរបស់អ្នកមានចំណេះដឹងនិងឧត្តមភាពរបស់គាត់ | «ឧត្តមភាពរបស់អ្នកមានចំណេះដឹងប្រសើរជាងអ្នកធ្វើអ៊ីហ្បាហ្ទាត់ប្រៀបដូចជាឧត្តមភាពរបស់ខ្ញុំលើអ្នកដែលមានឋានៈទាបជាងគេបំផុតក្នុងចំណោមពួកអ្នក»។ «អ្នកនាំសារបានមានប្រសាសន៍ថា អល់ឡោះ និងទេវតារបស់ទ្រង់ព្រមជាមួយនឹងអ្នកដែលនៅលើមេឃប្រាំពីរជាន់និងនៅលើដីប្រាំពីជាន់រហូតដល់សត្វស្រមោចនៅក្នុងរន្ធ និងត្រីនៅក្នុងសមុទ្រ សុំពរជ័យជូនដល់អ្នកដែលបង្រៀនសេចក្តីល្អដល់មនុស្សលោក»។ |
| ៤៩ | អ្នកដែលសុំពីអល់ឡោះឱ្យខ្លួនស្លាប់ស្ហាហ៊ីតដោយចិត្តស្មោះត្រង់ | «បុគ្គលណាសុំពីអល់ឡោះឱ្យខ្លួនស្លាប់ស្ហាហ៊ីតដោយចិត្តស្មោះត្រង់ អល់ឡោះនឹងឱ្យគាត់ឈានដល់ឋានៈរបស់ពួកអ្នកស្លាប់ស្ហាហ៊ីត ដ្បិតគាត់ស្លាប់នៅលើគ្រែក៏ដោយ»។ |





| | | |
|---|---|---|
| ៥០ | យំដោយសារខ្លាចអល់ឡោះនិងការយាមក្នុងផ្លូវរបស់ទ្រង់ | «ភ្នែកពីរដែលភ្លើងនរកមិនប៉ះពាល់ គឺភ្នែកដែលយំដោយសារកោតខ្លាចអល់ឡោះ ហើយនិងភ្នែកយាមពេលយប់ដើម្បីផ្លូវអល់ឡោះ»។ |
| ៥១ | បោះបង់ការព្យាបាលដោយដុត ដោយមន្តអាគម និងដោយមើលប្រផ្នូល | «គេពន្យល់សប្តិណាពីឱ្យឃើញអុម៉ាត់របស់គាត់ ក្នុងចំណោមពួកគេចំនួន៧ម៉ឺននាក់បានចូលឋានសួគ៌ដោយមិនជំនុំជំរះនិងមិនរងទារុណកម្ម ពួកអ្នកទាំងនោះគឺពួកអ្នកដែលមិន ព្យាបាលដោយដុតកម្តៅចស្បែក មិនព្យាបាលដោយមន្តអាគម និងមិនមើលប្រផ្នូល»។ |
| ៥២ | អ្នកដែលស្លាប់ហើយមានកូនតូចៗស្លាប់ហើយមានកូនតូចៗ | «អ្នកឥស្លាមគ្រប់រូបដែលមានកូនបីនាក់មិនទាន់គ្រប់អាយុ ហើយស្លាប់ចោលកូនទាំងនោះគឺអល់ឡោះនឹងឱ្យគេចូលឋានសួគ៌»។ |
| ៥៣ | អ្នកដែលខ្វាក់ភ្នែក ហើយគេអត់ធ្មត់ | «អល់ឡោះបានមានព្រះបន្ទូលថា នៅពេលយើងសាកល្បងខ្ញុំបម្រើរបស់យើងឱ្យបាត់បង់របស់ពីរដែលជាទីស្រលាញ់របស់គេ ហើយគេអត់ធ្មត់ យើងនឹងជំនួសរបស់ទាំងពីរនោះឱ្យគេវិញដោយឋានសួគ៌» របស់ទាំងពីរនោះគឺភ្នែកទាំងគូរ»។ |
| ៥៤ | អ្នកដែលបោះបង់អ្វីមួយដើម្បីអល់ឡោះ | «អ្នកមិនបោះបង់អ្វីមួយដោយសារខ្លាចអល់ឡោះលើកលែងតែអល់ឡោះប្រទានឱ្យអ្នកវិញនូវអ្វីល្អប្រសើរជាងនោះ» |
| ៥៥ | អ្នកដែលថែរក្សាប្រដាប់ភេទនិងអណ្តាត | «អ្នកណាដែលធានាជាមួយខ្ញុំនូវអ្វីដែលនៅចន្លោះពុកមាត់និងពុកចង្ការបស់គេ និងអ្វីដែលនៅចន្លោះជើងរបស់គេ គឺខ្ញុំធានាចំពោះគេវិញនូវឋានសួគ៌»។ គឺអណ្តាតនិងប្រដាប់ភេទ» |
| ៥៦ | អ្នកដែលសូត្រ «بسم الله» នៅពេលចូលផ្ទះនិងនៅពេលហូបអាហារ | «នៅពេលបុរសម្នាក់បានចូលផ្ទះរបស់គេ ហើយគេហ្សិកៀរចំពោះអល់ឡោះនៅពេលចូលនិងនៅពេលបរិភោគអាហារ ស្សៃតននិយាយថា អត់មានកន្លែងដេកនិងអាហារសម្រាប់ពួកអ្នកទេ។ តែបើគេចូលហើយមិនបានហ្សិកៀរចំពោះអល់ឡោះនៅពេលចូល ស្សៃតនបាននិយាយថា ពួកអ្នកមានកន្លែងដេកហើយ ហើយនៅពេលគេមិនបានហ្សិកៀរចំពោះអល់ឡោះនៅពេលបរិភោគអាហាររបស់គេ នោះស្សៃតនបាននិយាយថា ពួកអ្នកមានកន្លែងដេក និងអាហារហូបហើយ»។ |



| | | |
|---|---|---|
| ៥៧ | ទូអា ក្រោយពេលហូបអាហារ ផឹកទឹក និងពាក់សម្លៀកបំពាក់ថ្មី | «អ្នកណាបានបរិភោគអាហារ រួចគេសូត្រថា៖ «اَلْحَمْدُ لِلهِ الَّذِيْ أَطْعَمَنِىْ هَذَا وَرَزَقَنِيْهِ مِنْ غَيْرِ حَوْلٍ مِنِّىْ وَلاَ قُوَّةٍ» (អាល់ហាំទូលីលទ្បើហ៊ីលទ្បើហ្ស៊ីអោតអាម៉ាណីហើហ្សើ វ៉ារ៉ហ្សើក៏ណីហ៊ី មិនហូឈរីហៅលីន មិនណីវ៉ាទ្បើគូវ៉ះ) មានន័យថា៖ការសរសើរទាំងឡាយចំពោះទ្រង់ ដែលជាអ្នកផ្តល់អាហារនេះដល់យើងខ្ញុំ និងផ្តល់លាភសក្ការៈមកឱ្យខ្ញុំដែលមិនមែនជាអនុភាព ឬកំលាំងពលំចេញពីរូបខ្ញុំឡើយ។ គឺទ្រង់អភ័យទោសឱ្យគេនូវអំពើបាបដែលកន្លងហួស»។ «ហើយនៅពេលផឹកទឹក ទូអាថា៖ «اَلْحَمْدُ لِلّهِ الَّذِيْ كساني هَذَا...» (អាល់ហាំទូលីលទ្បើហ៊ីលទ្បើហ្ស៊ី សើក៏ណីហើហ្សើ....) មានន័យថា៖ការសរសើរទាំងឡាយចំពោះទ្រង់ ដែលជាអ្នកផ្តល់ទឹកនេះដល់យើងខ្ញុំ ហើយនៅពេលពាក់សម្លៀកបំពាក់ថ្មីគេទូអាថា៖ «اَلْحَمْدُ للهِ الَّذِيْ سقاني هَذَا.» (អាល់ហាំទូលីលទ្បើហ៊ីលទ្បើហ្ស៊ី កើសើណីហើហ្សើ....) មានន័យថា៖ការសរសើរទាំងឡាយចំពោះទ្រង់ ដែលជាអ្នកផ្តល់សម្លៀកបំពាក់នេះដល់យើងខ្ញុំ |
| ៥៨ | អ្នកដែលចង់ឱ្យអល់ឡោះសម្រាលដល់ការលំបាកក្នុងផ្ទះនិងផ្សេងៗទៀត | «ហ្វាទីម៉ះបានសុំខ្ញុំបម្រើម្នាក់ពីណាពី។ ណាពីបាននិយាយទៅកាន់គាត់និងអាលីថា តើអ្នក មិនចង់ឱ្យខ្ញុំប្រាប់អ្នកទាំងពីរពីប្រការល្អជាងអ្វីដែលអ្នកទាំងពីរសុំខ្ញុំទេឬ? គឺនៅពេលអ្នកទាំងពីរចូលសំរាន សូត្រ«الله أكبر» ចំនួន៣៤ដង សូត្រ « سُبْحَانَ اللهِ » ចំនួន៣៣ដង ហើយនឹងសូត្រ «اَلْحَمْدُ لِلهِ» ចំនួន៣៣ដងគឺប្រសើរសម្រាប់អ្នកទាំងពីរជាងបានខ្ញុំបម្រើទៅទៀត»។ |
| ៥៩ | ទូអាមុនរួមដំណេក | «បើនរណាម្នាក់ចង់រួមដំណេកជាមួយប្រពន្ធរបស់គេ ហើយគេសូត្រថា«بِسْمِ اللهِ اَللَّهُمَّ جَنِّبْنَا الشَّيْطَانَ وَجَنِّبِ الشَّيْطَانَ مَا رَزَقْتَنَا» (ពិសមីលទ្បើហ៍អល់ឡោះហ៊ុំម៉ាយ៉ាន់នីបណាសស្ហៃតន វ៉ាយ៉ាននីពីសស្ហៃតនណាម៉ារ៉ហ្សក់តាណា) មានន័យថា៖ក្នុងនាមអល់ឡោះ!ឱអល់ឡោះជាម្ចាស់! សូមទ្រង់បញ្ចៀសយើងខ្ញុំឱ្យឆ្ងាយពីស្ហៃតន និងបញ្ចៀសពួកស្ហៃតនឱ្យឆ្ងាយពីអ្វីដែលទ្រង់បានប្រទានឱ្យយើងខ្ញុំ(កូន)។ ហើយបើអល់ឡោះកំណត់ឱ្យអ្នកទាំងពីរមានកូននៅពេលនោះ ស្ហៃតន្តនមិនអាចបង្គ្រោះថ្នាក់ដល់គេជាដាច់ខាត»។ |





| | | |
|---|---|---|
| ៦០ | ស្ត្រីចេះបំពេញចិត្តប្តី | «បើសិនជានាងសឡាតប្រាំពេល បួសក្នុងខែរ៉ម៉ាឌន រក្សាខ្លួនប្រាណរបស់នាង ហើយប្រតិបត្តិចំពោះប្តី។ គេនិយាយទៅកាន់នាងថាចូរនាងចូលឋានសួគ៌ទៅតាមទ្វារណាដែលនាងចង់»។ «ស្ត្រីណាម្នាក់ដែលបានស្លាប់ទៅ ហើយប្តីរបស់នាងអធ្យាស្រ័យចំពោះនាង គឺនាងនឹងចូលឋានសួគ៌»។ |
| ៦១ | រាប់ញាតិ | «នរណាចង់បានជីវភាពធូរធានិងមានអាយុវែង ចូរអ្នកនោះត្រូវរាប់អានសាច់ញាតិ»។ |
| ៦២ | ចិញ្ចឹមផ្គត់ផ្គង់ដល់កូនកំព្រា | «ខ្ញុំនឹងអ្នកដែលចិញ្ចឹមកូនកំព្រានៅក្នុងឋានសួគ៌ដូចនេះ គាត់បាននិយាយដោយធ្វើសញ្ញាម្រាមដៃទាំងពីររបស់គាត់គឺដៃចង្អុលនិងដៃកណ្ដាល។ |
| ៦៣ | សីលធម៌ល្អ | «ពិតណាស់អ្នកមានជំនឿ ដែលមានសីលធម៌ល្អរបស់គេមានឋានៈដូចអ្នកដែលបួសនិងអ្នកដែលក្រោកសឡាតពេលយប់»។ ផ្ទះនៅក្នុងឋានសួគ៌ជាន់លើបំផុតសម្រាប់អ្នកដែលមានសីលធម៌ល្អ»។ |
| ៦៤ | មេត្តាករុណា និងអាណិតស្រលាញ់ចំពោះមឺខលោក( សត្វលោក ) ទាំងឡាយ | «ជាការពិតណាស់អល់ឡោះមេត្តាករុណាចំពោះខ្ញុំរបស់ទ្រង់ណាដែលមានចិត្តមេត្តាករុណា ចូរពួកអ្នកមេត្តាចំពោះអ្នកនៅលើផែនដី នោះអ្នកនៅលើមេឃនឹងមេត្តាករុណាចំពោះពួកអ្នកវិញ»។ |
| ៦៥ | ស្រលាញ់អំពើល្អសម្រាប់អ្នកមូស្លីម | «ពួកអ្នកពុំទាន់មានជំនឿពេញលេញទេ លុះត្រាតែគេស្រលាញ់ចំពោះបងប្អូនរបស់គេដូចដែលគេស្រលាញ់ចំពោះខ្លួនឯង»។ |
| ៦៦ | ភាពខ្មាសអៀន | «ការខ្មាសអៀនមិនបាននាំអ្វីមក ក្រៅពីប្រការល្អឡើយ»។ «ភាពខ្មាសអៀនជាចំណែកមួយនៃជំនឿ»។ «បួនប្រការជាស៊ុណ្ណះរបស់ពួកអ្នកនាំសារគឺភាពខ្មាសអៀន លាបទឹកអប់ ប្រើឈើដុសធ្មេញ និងយកប្រពន្ធ»។ |
| ៦៧ | ផ្ដើមឱ្យសាឡាម មុន | «មានបុរសម្នាក់ទៅជួបណាពី រួចឱ្យសាឡាមទៅណាពី « السَّلَامُ عَلَيْكُمْ» ណាពីបានមានប្រសាសន៍ថា ទទួលបានផលបុណ្យ១០។ រួចមានបុរសម្នាក់ទៀតពោលថា «السلام عليكم ورحمة الله» ណាពីបានមានប្រសាសន៍ថា ទទួលបានផលបុណ្យ២០។ ក្រោយមកមានបុរសម្នាក់ទៀតមកជួបលោក ហើយពោលថា «السلام عليكم ورحمة الله وبركاته» គេទទួលបានផលបុណ្យ៣០»។ |
| ៦៨ | ចាប់ដៃនៅពេលជួបគ្នា | «គ្មានអ្នកឥស្លាមពីរនាក់ណាដែលបានជួបគ្នាហើយបានចាប់ដៃគ្នាលើកលែងតែទ្រង់អភ័យទោសឱ្យគេ |





| | | |
|---|---|---|
| | | រហូតដល់គេទាំងពីរបែកគ្នា»។ |
| ៦៩ | បុគ្គលដែលការពារកិត្តិយសបងប្អូនឥស្លាមរបស់ខ្លួន | «បុគ្គលណាការពារកិត្តិយសបងប្អូនរបស់ខ្លួន នៅថ្ងៃគីយ៉ាម៉ាត់អល់ឡោះការពារមុខរបស់គេពីភ្លើងនរក»។ |
| ៧០ | ស្រលាញ់អ្នកសលីហ៊ីន និងរាប់អានពួកគាត់ | «អ្នកនឹងបាននៅជាមួយនឹងមនុស្សដែលអ្នកស្រលាញ់»។អានីសនិយាយថា «គ្មានហាទីសណាធ្វើឱ្យសហាហ្គាត់របស់លោកសប្បាយចិត្តជាង ហាទីសនេះទេ»។ |
| ៧១ | ស្រលាញ់គ្នាដើម្បីអល់ឡោះ | «អល់ឡោះបានមានបន្ទូលថា ពួកអ្នកដែលស្រឡាញ់គ្នាដើម្បីយើង ពួកគេនឹងទទួលបានវេទិកាធ្វើពីពន្លឺដែលណាពីៗនិងស៊ូហាហ្ទាកទាំងឡាយប្រាថ្នាសុំសម្រាប់ពួកគេ»។ |
| ៧២ | អ្នកដែលទូអាឱ្យបងប្អូនមូស្លីមរបស់គេ | «បុគ្គលណាបានទូអាឱ្យបងប្អូនរបស់គេពីក្រោយខ្នង គឺទេវតាដែលទទួលភារកិច្ចរក្សាគេបាននិយាយថា អាមីន ហើយសម្រាប់អ្នកក៏ដូចនេះដែរ»។ |
| ៧៣ | សុំការអភ័យឱ្យអ្នកមានជំនឿប្រុសនិងអ្នកមានជំនឿស្រី | «បុគ្គលណាសុំការអភ័យទោសឱ្យអ្នកមានជំនឿប្រុសនិងអ្នកមានជំនឿស្រី គឺអល់ឡោះនឹងកត់ត្រាឱ្យគេដោយក្នុងអ្នកមានជំនឿប្រុសនិងអ្នកជំនឿស្រីម្នាក់ទទួលបានផលបុណ្យមួយ»។ |
| ៧៤ | ការសុំអាត់របស់ដែលបង្កបញ្ហាចេញពីផ្លូវ | ខ្ញុំបានឃើញបុរសម្នាក់បានចូលឋានសួគ៌ដោយសារគាត់បានកាត់ដើមឈើដែលនៅលើផ្លូវដែលបង្កបញ្ហាដល់អ្នកឥស្លាម។ |
| ៧៥ | បោះបង់ការឈ្លោះគ្នានិងនិយាយកុហក | «ខ្ញុំធានាឱ្យទទួលបានផ្ទះមួយនៅក្នុងសួននៃឋានសួគ៌សម្រាប់អ្នកដែលមិនឈ្លោះប្រកែក ទោះគេជាអ្នកត្រូវហើយទទួលបានផ្ទះនៅចំកណ្តាលឋានសួគ៌សម្រាប់អ្នកដែលមិននិយាយកុហក ទោះបីជាការលេងសើចក៏ដោយ» |
| ៧៦ | អ្នកដែលទប់កំហឹង | «បុគ្គលណាទប់កំហឹងបានខណៈពេលដែលគេអាចបញ្ចេញវាបាន នៅថ្ងៃគីយ៉ាម៉ាត់អល់ឡោះហៅគេក្នុងចំណោមសត្វលោកទាំងឡាយ ដើម្បីឱ្យគេជ្រើសរើសទេពអក្សរមួយណាដែលគេប្រាថ្នាចង់បាន»។ |
| ៧៧ | អ្នកដែលគេសរសើរថាល្អ | «បុគ្គលដែលពួកអ្នកសរសើរថាល្អនោះនឹងបានចូលឋានសួគ៌។ ចំណែកបុគ្គលដែលពួកអ្នកនិយាយថាអាក្រក់ នឹងចុះឋាននរក។ ពួកអ្នកគឺជាសាក្សីរបស់អល់ឡោះនៅលើផែនដី។ ពួកអ្នកគឺជាសាក្សី.....» |





| | | |
|---|---|---|
| ៧៨ | បុគ្គលដែលជួយដោះទុក្ខកង្វល់អ្នកមូស្លីម ជួយសម្រួលដល់គេ បិតបាំងគេ និងជួយគេ | «បុគ្គលណាជួយដោះទុក្ខមួយសម្រាប់អ្នកឥស្លាមនៅក្នុងលោកីយ៍នេះ អល់ឡោះនឹងជួយដោះទុក្ខគេវិញនៅថ្ងៃអាឃីរ៉ាត់។ បុគ្គលណាជួយសម្រួលការលំបាកមួយដល់អ្នកដែលទទួលលំបាក នោះអល់ឡោះនឹងជួយសម្រួលដល់គេទាំងលោកីយ៍និងថ្ងៃអាឃីរ៉ាត់។ បុគ្គលណាជួយបិតបាំងអ្នកមូស្លីម អល់ឡោះនឹងបិតបាំងគេវិញនៅថ្ងៃគីយ៉ាម៉ាត់។ អល់ឡោះជួយខ្ញុំរបស់ទ្រង់ដរាបណាគេចេះជួយបងប្អូនរបស់គេ។ បុគ្គលណាដើរតាមផ្លូវមួយដើម្បីស្វែងរកចំណេះវិជ្ជា អល់ឡោះនឹងសម្រួលដល់គេនូវផ្លូវទៅកាន់ឋានសួគ៌។ គ្រប់ក្រុមនីមួយៗដែលជួបជុំគ្នានៅក្នុងម៉ាស្ជិតណាមួយ ដើម្បីសូត្រគម្ពីររបស់អល់ឡោះនិងបង្រៀនគ្នាទៅវិញទៅមកនោះ ភាពនឹងនរនឹងសណ្ឋិតលើពួកគេ ក្តីមេត្តាករុណានឹងគ្របដណ្តប់លើពួកគេ។ ម៉ាឡាអ៊ីកាត់ព័ទ្ធជុំវិញពួកគេ ហើយអល់ឡោះរំឭកពួកគេនៅក្នុងចំណោមអ្នកដែលនៅឯទ្រង់ ហើយបុគ្គលណាអំពើល្អរបស់គេខ្វះខាត នោះពូជពង្សវង្សត្រកូលរបស់គេមិនអាចជួយគេថ្កើងឋានបានឡើយ។ |
| ៧៩ | មេដឹកនាំយុត្តិធម៌ យុវជនល្អប្រពៃ ចិត្តជាប់នឹងម៉ាស្ជិត ស្រលាញ់គ្នាដើម្បីអល់ឡោះ រក្សាភាពស្អាតស្អំមិនប្រព្រឹត្តអំពើហារ៉ាម និងបរិច្ចាគដោយសម្ងាត់។ | «ពិតណាស់ នៅថ្ងៃបរលោកមានមនុស្សប្រាំពីរប្រភេទដែលអល់ឡោះជាម្ចាស់ឱ្យពួកគេជ្រកនៅក្រោមម្លប់របស់ទ្រង់នៅថ្ងៃដែលគ្មានម្លប់ណាក្រៅពីម្លប់របស់ទ្រង់ឡើយ។ ទីមួយ អ្នកដឹកនាំយុត្តិធម៌។ ទីពីរយុវជនដែលសកម្មក្នុងការគោរពសក្ការៈចំពោះអល់ឡោះ។ ទីបី បុរសដែលចិត្តរបស់គេជិតជាប់នឹងម៉ាស្ជិត។ ទីបួន បុរសពីរនាក់ស្រលាញ់គ្នាក្នុងនាមអល់ឡោះ ជួបគ្នាដើម្បីអល់ឡោះ បែកគ្នាដើម្បីអល់ឡោះ។ ទីប្រាំ បុរសដែលត្រូវស្ត្រីមានបុណ្យសក្តិ មានទ្រព្យសម្បត្តិស្តុកស្តម្ភ និងមានសម្រស់ស្រស់ស្អាត បបួលឱ្យប្រព្រឹត្តអំពើផិតតែគេនិយាយថាខ្ញុំខ្លាចអល់ឡោះជាម្ចាស់។ ទីប្រាំមួយ បុរសដែលដៃឆ្វេងរបស់គេមិនដឹងនៅពេលដៃស្តាំរបស់គេយកទ្រព្យទៅបរិច្ចាគ។ ទីប្រាំពីរ បុរសដែលហ្សីកៀរចំពោះអល់ឡោះនៅម្នាក់ឯង ហើយគេបង្ហូរទឹកភ្នែក»។ |
| ៨០ | ការសុំអភ័យទោសពីអល់ឡោះ | ជនណាដែលតែងតែសុំអភ័យទោសពីអល់ឡោះ អល់នឹងអោយគេមានច្រកចេញរាល់ពេលលំបាក និងពិបាកចិត្ត ហើយទ្រង់នឹងប្រទានលាភសក្ការៈដល់គេដោយនឹងស្មានមិនដល់។ |



# ប្រការដែលហាមឃាត់ និងមិនឱ្យប្រព្រឹត្ត

| ល | ប្រការគេហាមឃាត់ | ភស្តុតាងបញ្ជាក់ពីហាទីសត្រឹមត្រូវដែលរាយការណ៍មកពីណាពី |
|---|---|---|
| ១ | ធ្វើល្អប្រាថ្នាចង់បានសគុណពីមនុស្ស | «អល់ឡោះជាម្ចាស់បានបន្ទូលថា ទ្រង់ពុំត្រូវការគេយកនរណាម្នាក់ មកចូលហ៊ុនជាមួយទ្រង់ ក្នុងការតាំងចិត្តប្រាថ្នាឬចង់បានផលបុណ្យ។បើសិនជានរណាម្នាក់យកអ្វីផ្សេងក្រៅពីទ្រង់មកចូលហ៊ុនជាមួយក្នុងការប្រាថ្នា ឬការផ្សេង ពិតប្រាកដអល់ឡោះទ្រង់នឹងទុកចោលជាមួយអ្នកដែលគេយកមកចូលហ៊ុននោះ» |
| ២ | ចង់បានមុខមាត់និងល្បីឈ្មោះ | «បុគ្គលណាចង់ល្បីឈ្មោះ អល់ឡោះនឹងបកអាក្រាតរឿងអាស្រូវរបស់គេនៅថ្ងៃបរលោក ហើយបុគ្គលណាចង់បានមុខមាត់ អល់ឡោះនឹង បកអាក្រាតអាថ៌កំបាំងរបស់គេ (នៅថ្ងៃបរលោក) »។ |
| ៣ | ក្រអឺតក្រទម (الكبر) | «មិនបានចូលឋានសួគ៌ទេ បុគ្គលដែលមានចិត្តក្រអឺតក្រទមតូចប៉ុនលំអងធូលី»។ |
| ៤ | ការកុហក | «ក្ដីវិនាសសម្រាប់អ្នកដែលនិយាយកុហកដើម្បីឱ្យគេសើចសប្បាយ វិនាសសម្រាប់គេ វិនាសសម្រាប់គេ»។ |
| ៥ | អំពើបាបនិងវិបត្តិ | «គេបង្ហាញការសាកល្បងទៅក្នុងដួងចិត្តប្រៀបបីដូចជាកន្ទេលដែលគេត្បាញម្ដងមួយៗ បើដួងចិត្តណាទទួលយកវិបត្តិនោះ គេនឹងដៅចំនុចខ្មៅមួយនៅក្នុងដួងចិត្តនោះ»។ |
| ៦ | ការប្រាក់ | «រ៉សូលុលឡោះដាក់បណ្ដាសាចំពោះអ្នកដែលស៊ីការប្រាក់ និងអ្នកបង់ការប្រាក់»។ «ការប្រាក់មួយឌៀរហាំមដែលបុរសម្នាក់ស៊ី ហើយគេដឹងថាវាជាការប្រាក់នោះ ទោសរបស់គេធ្ងន់ជាង៣៦នាក់នៃពួកអ្នកហ្ស៊ីណា»។ |
| ៧ | ញៀនស្រា | «ប្រាំក្រុមមិនបានចូលឋានសួគ៌គឺអ្នកញៀនស្រា អ្នកដែលជឿលើអំពើអាបធ្មប់ អ្នកកាត់កាលសាច់ញាតិ គ្រូទាយ អ្នកដែលធ្វើល្អចង់បានគុណសម្បត្តិ»។ |
| ៨ | ការកុហក | «ក្ដីវិនាសសម្រាប់អ្នកដែលនិយាយកុហកដើម្បីឱ្យគេសើចសប្បាយ វិនាសសម្រាប់គេ វិនាសសម្រាប់គេ»។ |
| ៩ | ស៊ើបអង្កេត | «ជនណាលបស្ដាប់ការជជែកគ្នារបស់ក្រុមមួយ ហើយគេមិនចង់ឱ្យស្ដាប់ ឬពួកគេរត់ចេញពីអ្នកនោះ នៅថ្ងៃគីយ៉ាម៉ាត់គេនឹងចាក់ទឹកសំណចូលក្នុងត្រចៀករបស់គេ»។ |
| ១០ | គូររូប | «ពិតណាស់មនុស្សដែលទទួលទណ្ឌកម្មខ្លាំងបំផុតនៅថ្ងៃបរលោកគឺពួកអ្នកដែលគូររូប» «ម៉ាឡាអ៊ីកាត់នឹងមិនចូលផ្ទះដែលមានផ្ទៃ ឬ |





| | | |
|---|---|---|
| | | រូបភាពឡើយ»។ |
| ១១ | និយាយបង្កាច់គេ | «មិនបានចូលឋានសួគ៌ទេ ពួកអ្នកដែលនិយាយបង្កាច់គេ» ។គឺនិយាយក្នុងបំណងបំផ្លាញគេ ។ |
| ១២ | និយាយដើមគេក្រអូប | «តើពួកអ្នកដឹងទេ អ្វីហៅថានិយាយដើមគេ? ពួកគេឆ្លើយថា អល់ឡោះ និងរ៉សូលដឹងបំផុត។ លោកក៏មានប្រសាសន៍ថា គឺនិយាយអ្វីដែលបងប្អូនរបស់អ្នកមិនពេញចិត្ត»។ គេបានសួរថា តើលោកយល់យ៉ាងណាដែរ ប្រសិនបើអ្វីដែលខ្ញុំនិយាយឱ្យបងប្អូនខ្ញុំនោះជាការពិត? លោកបានឆ្លើយ ប្រសិនបើគេដូចអ្វីដែលអ្នកនិយាយមែន គឺអ្នកបាននិយាយដើមគេ។ ហើយ ប្រសិនបើគេមិនដូចអ្វីដែលអ្នកនិយាយគឺអ្នកបាននិយាយបង្កាច់គេ»។ |
| ១៣ | ដាក់បណ្ដាសា | «ដាក់បណ្ដាសាអ្នកមុកមីនស្មើនឹងសម្លាប់គេ»។ «អ្នកដែលប្រទេចផ្ដាសាគេនោះ មិនអាចក្លាយជាអ្នកសង្គ្រោះគេនៅថ្ងៃបរលោក ហើយមិនអាចក្លាយជាសាក្សីគេ»។ |
| ១៤ | បរិហារកេរ្តិ៍គេ | «នៅថ្ងៃបរលោក មនុស្សដែលអាក្រក់បំផុតចំពោះអល់ឡោះគឺបុរសដែលបានរួមដំណេកជាមួយប្រពន្ធរបស់គេ និងប្រពន្ធរបស់គេបានរួមដំណេកជាមួយគេ បន្ទាប់មកគេបានយករឿងអាថ៌កំបាំងរបស់នាងទៅផ្សព្វផ្សាយ»។ |
| ១៥ | ការឈ្នានីស | «ចូរពួកអ្នកប្រុងប្រយ័ត្នចំពោះការឈ្នានីសគ្នា ព្រោះការឈ្នានីសវាបំផ្លាញទង្វើល្អ ដូចជាភ្លើងឆេះអូសស្ងួត»។ ឬលោកមានប្រសាសន៍ថា «ស្មៅ» |
| ១៦ | ចោទអ្នកមូស្លីមថាកាហ្វៀរ | «នៅពេលដែលបុរសម្នាក់និយាយទៅកាន់បងប្អូនរបស់គាត់ថា កាហ្វៀរ។ ពាក្យនេះនឹងត្រូវធ្លាក់ទៅលើនរណាម្នាក់ក្នុងចំណោមពួកគេទាំងពីរ។ បើសិនជាពិត ក្លាយជាកាហ្វៀរដូចគេថា បើពុំនោះទេត្រូវធ្លាក់មកលើខ្លួនឯងវិញ»។ |
| ១៧ | ដាក់ត្រកូលខ្លួនផ្សេងពីឪពុកខ្លួន | «ជនណាយកត្រកូលផ្សេងពីឪពុករបស់ខ្លួន ដោយគេដឹងថាអ្នកនោះមិនមែនជាឪពុករបស់គេ គឺត្រូវគេហាមមិនឱ្យចូលឋានសួគ៌»។ «ជនណាដែលស្អប់ឪពុកខ្លួនឯង ជននោះជាកាហ្វៀរ» |
| ១៨ | បំភ័យអ្នកមូស្លីម | «គេមិនអនុញ្ញាតឱ្យអ្នកមូស្លីមបំភ័យអ្នកមូស្លីមដូចគ្នាទេ»។« បុគ្គលណាដែលយកដែកភ្ជង់អ្នកមូស្លីម ពិតណាស់ទេវតាដាក់បណ្ដាសាគេរហូតដល់គេឈប់ភ្ជង់»។ |
| ១៩ | សម្លាប់អ្នកដែលសុំសិទ្ធិជ្រកកោនក្នុងប្រទេសឥស្លាម | «ជនណាសម្លាប់ដោយខុសច្បាប់ចំពោះជនដែលជាប់កិច្ចសន្យា នោះគេមិនបានធុំក្លិនឋានសួគ៌ទេ ហើយក្លិនរបស់វាឋិតនៅចម្ងាយ១០០ឆ្នាំ»។ |
| ២០ | ចងសត្រូវជាមួយនឹងវ៉ាលីអល់ឡោះ | បុគ្គលណាចងសត្រូវជាមួយនឹងអ្នកដែលមានជំនឿនិងកោតខ្លាចចំពោះអល់ឡោះ យើងនឹងប្រកាសសង្គ្រាម |



| | | |
|---|---|---|
| | | ជាមួយបុគ្គលនោះ» |
| ២១ | កុំលើកអ្នកមូណាហ្វិកនិងអ្នកហ្វាសិកជាចៅហ្វាយ | «ចូរពួកអ្នកកុំហៅពួកមូណាហ្វិកថាចៅហ្វាយ ហើយបើគេក្លាយជាចៅហ្វាយមែន ពិតណាស់ ពួកអ្នកធ្វើឱ្យព្រះជាម្ចាស់ខឹងនឹងពួកអ្នក»។ |
| ២២ | ស្ត្រីចេញដំណើរដោយប្រើគ្រឿងក្រអូប | «គ្រប់ភ្នែកទាំងអស់គឺហ្ស៊ីណា។ នៅពេលដែលស្ត្រីលាបទឹកអប់ ហើយដើរកាត់មនុស្សប្រុសមួយក្រុម គឺនាងដូចអ៊ីចេះ។ មានន័យថា ហ្ស៊ីណា»។ |
| ២៣ | កាត់ហ្វូកូមដោយអវិជ្ជា | «បុគ្គលណាគេកាត់ហ្វូកុមឱ្យដោយអវិជ្ជា គឺកំហុសរបស់គេធ្លាក់ទៅលើអ្នកដែលបានកាត់ហ្វូកុមឱ្យនោះ»។ |
| ២៤ | បោះបង់សឡាតជុំអាត់និងបោះបង់សឡាតអាសើរ | «បុគ្គលណាដែលបានបោះបង់សឡាតជុំអាត់ចំនួនបីដង ដោយប្រមាទ និងប្រហែស អល់ឡោះនឹងបោះត្រាក្នុងចិត្តរបស់គេ»។ «ជនណាបោះបង់សឡាតអាសើរ នោះ អាម៉ាលរបស់គេត្រូវចាត់ទុកជាមោឃៈ »។ |
| ២៥ | ធ្វេសប្រហែសក្នុងការសឡាត | «កិច្ចសន្យារវាងយើងនិងពួកគេគឺសឡាត ជនណាបោះបង់សឡាត ជននោះជាកាហ្វៀរ»។ «រវាងបុគ្គលម្នាក់និងអំពើស្ហ៊ីរិកគឺសឡាត»។ |
| ២៦ | ដើរកាត់មុខអ្នកសឡាត | «បើសិនជាបុគ្គលដែលដើរកាត់មុខអ្នកសឡាតដឹងថាបាបកម្មវាកម្រឹតណានោះ គេនឹងឈររង់ចាំរយៈពេល៤០ (ឆ្នាំ ឬខែ) ប្រសើរជាងដើរកាត់មុខអ្នកសឡាតនោះ»។ |
| ២៧ | នាំក្លិនអាក្រក់មកម៉ាស្ជិត | «បុគ្គលណាហូបខ្ទឹមបារាំង ខ្ទឹមសឬក្រហម គុយឆាយចូរកុំមកជិតម៉ាស្ជិតរបស់ពួកយើង ព្រោះពួកម៉ាឡាអ៊ីកាត់ទទួលរងការធុំខ្លិនអាក្រក់ពីអ្វីដែលមនុស្សលោកទទួលរងនូវខ្លិនអាក្រក់ដែរ»។ |
| ២៨ | ប្លន់យកដីគេ | «បុគ្គលណាប្លន់យកដីគេមួយចំអាម នៅថ្ងៃគីយ៉ាម៉ាត់អល់ឡោះនឹងយកដីប្រាំពីរជាន់ទៅរុំព័ទ្ធលើគេ»។ |
| ២៩ | និយាយពាក្យសម្ដីដែលធ្វើឱ្យអល់ឡោះក្រោធខឹង | «ពិតប្រាកដ បុគ្គលណាបាននិយាយពាក្យសម្ដីដែលធ្វើឱ្យអល់ឡោះក្រោធខឹង ដោយគេមិនខ្វល់អ្វីសោះនោះ គេនឹងធ្លាក់ចូលក្នុងឋាននរកដោយសារពាក្យសម្ដីនោះរយៈពេល៧០ឆ្នាំ»។ |
| ៣០ | និយាយច្រើនក្រៅពីហ្ស៊ីកៀរ អល់ឡោះ | «ចូរពួកអ្នកកុំនិយាយច្រើនក្រៅពីហ្ស៊ីកៀរអល់ឡោះ ពីព្រោះការនិយាយច្រើនក្រៅពីហ្ស៊ីកៀរអល់ឡោះវាធ្វើ ឱ្យចិត្តរឹងរូស»។ |
| ៣១ | ពូកែបំភ្លៃវោហារ | «ពិតណាស់ អ្នកដែលខ្ញុំស្អប់បំផុតនៅក្នុងលោកីយ៍ ហើយឃ្លាតឆ្ងាយពីខ្ញុំនៅថ្ងៃបរលោកគឺអ្នកនិយាយច្រើន អ្នកដែល |

| | | |
|---|---|---|
| | | ពូកែបំភ្លៃវោហារ និងអ្នកដែលពូកែលែងសំដីធ្វើមាត់ធំៗ» |
| ៣២ | បោកប្រាស់កូនចៅ | «គ្មានបុគ្គលណាម្នាក់ដែលអល់ឡោះបានឱ្យគេក្លាយជាអ្នកគ្រប់គ្រងកូនចៅ ហើយគេស្លាប់នៅថ្ងៃដែលគេត្រូវអស់អាយុ ហើយគេជាអ្នកបោកប្រាស់កូនចៅរបស់គេ លើកលែងតែអល់ឡោះហាមគេពីឋានសួគ៌»។ |
| ៣៣ | ស្វែងរកចំណេះដឹងដើម្បីប្រយោជន៍លោកីយ៍ | «បុគ្គលណាស្វែងរកចំណេះដឹងអ្វីមួយក្នុងចំណោមចំនេះដឹងដែលគេស្វែងរកដើម្បីអល់ឡោះ តែបុគ្គលនោះបែរជាស្វែងរកដើម្បីផលប្រយោជន៍លោកីយ៍ គឺនៅថ្ងៃបរលោកគេនឹងមិនបានធុំក្លិនឋានសួគ៌ឡើយ»។ |
| ៣៤ | អ្នកឥស្លាមដែលឈប់រាប់អានគ្នា | «គេមិនអនុញ្ញាតឱ្យអ្នកឥស្លាមខឹងគ្នាលែងរាប់អានគ្នាលើសពីបីថ្ងៃ »។ «បុគ្គលណាដែលបោះបង់ខឹងលែងរាប់អានបងប្អូនរបស់គេចំនួនមួយឆ្នាំគឺហាក់បីដូចជាសម្លាប់គេ»។ |
| ៣៥ | អំពើបាបនិងវិបត្តិ | «គេបង្ហាញការសាកល្បងទៅក្នុងដួងចិត្តប្រៀបបីដូចជាកន្ទេលដែលគេត្បាញម្តងមួយៗ បើដួងចិត្តណាទទួលយកវិបត្តិនោះ គេនឹងដៅចំនុចខ្មៅមួយនៅក្នុងដួងចិត្តនោះ»។ |
| ៣៦ | ស្ត្រីសុំប្តីលែងលះ | «ស្ត្រីណាម្នាក់សុំប្តីលែងលះដោយគ្មានមូលហេតុ គឺគេហាមមិនឱ្យនាងធុំក្លិនឋានសួគ៌ឡើយ»។ |
| ៣៧ | ឱ្យគេហើយយកវិញ | «អ្នកដែលបានឱ្យគេហើយយកវិញប្រៀបដូចសត្វឆ្កែវាក្អួតហើយវាស៊ីកម្អួតខ្លួនឯង»។ |
| ៣៨ | ស្ត្រីបដិសេធមិនព្រមរួមដំណេកជាមួយប្តី | «នៅពេលប្តីហៅប្រពន្ធមករួមដំណេកជាមួយ តែនាងបដិសេធ ទេវតាដាក់បណ្តាសានាងរហូតដល់ពេលព្រឹក» |
| ៣៩ | សម្លឹងមើលប្រការហារ៉ាម (المحرمات) | «គេបានកំណត់លើកូនអាដាំនូវចំណែកនៃហ្ស៊ីណា គេចមិនផុតឡើយ។ ភ្នែកទាំងពីរហ្ស៊ីណាដោយការសម្លឹងមើល ត្រចៀកហ្ស៊ីណាដោយការស្តាប់ មាត់ហ្ស៊ីណាដោយការនិយាយ និងដៃហ្ស៊ីណាដោយ........ ហើយចិត្តដោយការប៉ងប្រាថ្នា ហើយការអនុវត្តជាក់ស្តែង ឬបដិសេធនោះអាស្រ័យលើប្រដាប់ភេទ»។ |
| ៤០ | ស្ត្រីរៀបការដោយគ្មានអាណាព្យាបាល | «ស្ត្រីណាម្នាក់រៀបការដោយគ្មានការអនុញ្ញាតពីអាណាព្យាបាល នោះការរៀបការរបស់នាងចាត់ទុកជាមោឃៈ ការរៀបការរបស់នាងចាត់ទុកជាមោឃៈ ការរៀបការរបស់នាងចាត់ទុកជាមោឃៈ»។ |
| ៤១ | អាពាហ៍ពិពាហ៍ស្ហ៊ីហ្គើរ | «ណាពីបានហាមរៀបការស្ហ៊ីហ្គើរ»។ គឺជន្លងនឹងគ្នាការកូនស្រីឱ្យគ្នាទៅវិញទៅមកដោយគ្មានបណ្ណាការ»។ |
| ៤២ | យំរៀបរាប់ | «បុគ្គលណាគេយំរៀបរាប់( នៅពេលគេស្លាប់ )គេនឹងដាក់ទណ្ឌកម្ម |



| | | |
|---|---|---|
| | | លើបុគ្គលនោះ នៅថ្ងៃបរលោកដោយសារការយំរៀបរាប់នោះ»។«រ៉សូលបានដាក់បណ្ដាសាចំពោះអ្នកដែលយំរៀបរាប់និងអ្នកដែលស្ដាប់ដក់ចិត្តនឹងការយំរៀបរាប់»។ |
| ៤៣ | ស្បថក្រៅពីអល់ឡោះ | «ជនណាដែលស្បថនឹងអ្វីក្រៅពីអល់ឡោះ គេពិត ជាក្លាយជាអ្នកកាហ្វៀរ ឬជាអ្នកស្ស៊ីរិក»។ «ជនណាដែលចង់ស្បថសូមស្បថនឹងអល់ឡោះ ឬនៅស្ងៀម»។ |
| ៤៤ | ស្បថកុហក | «បុគ្គលណាដែលស្បថកុហកដើម្បីកាត់យកមួយចំណែកនៃទ្រព្យរបស់អ្នកឥស្លាម គេស្បថបោកប្រាស់ គឺគេនឹងទៅជួបអល់ឡោះ ហើយទ្រង់ខឹងសម្បារចំពោះគេ» ។ |
| ៤៥ | ស្បថក្នុងការលក់ដូរ | «ចូរប្រុងប្រយ័ត្នចំពោះការស្បថច្រើនពេកក្នុងការលក់ដូរ ព្រោះវាធ្វើឱ្យទំនិញលក់ដាច់ តែគ្មានពរជ័យ»។ «ការស្បថធ្វើឱ្យទំនិញលក់ដាច់ ក៏ប៉ុន្តែប្រាក់ចំណេញគ្មានពរជ័យ»។ |
| ៤៦ | អ្នកដែលយកតំរាបអ្នកកាហ្វៀរ | «ជនណាប្រដូចខ្លួននឹងក្រុមណាមួយគឺគេស្ថិតក្នុងចំណោមក្រុមនោះ»។ «មិនមែនជាក្រុមរបស់យើងទេអ្នកដែលប្រដូចខ្លួនទៅនឹងអ្នកដទៃក្រៅពីយើង»។ |
| ៤៧ | ការរៀបឥដ្ឋធ្វើខឿនផ្នូរ | «រ៉ស៊ូលុលឡោះបានហាមការរៀបឥដ្ឋធ្វើខឿនលើផ្នូរ អង្គុយលើផ្នូរ និងសាងសង់លើផ្នូរ»។ |
| ៤៨ | ការក្បត់និងលាក់ពុត | «នៅថ្ងៃគីយ៉ាម៉ាត់ នៅពេលដែលអល់ឡោះបានប្រមូលផ្ដុំអ្នកជំនាន់មុននិងអ្នកជំនាន់ក្រោយ គេលើកទង់សម្រាប់រាល់អ្នកដែលក្បត់ គេហៅថា នេះគឺជាការក្បត់របស់អ្នកនេះកូនអ្នកនេះ»។ |
| ៤៩ | ការអង្គុយលើផ្នូរ | «ម្នាក់ក្នុងចំណោមពួកអ្នកអង្គុយលើរងើកភ្លើង ហើយវាឆេះខោរបស់គេធ្លុះដល់ស្បែកនោះប្រសើរជាងការអង្គុយលើផ្នូរ»។ |
| ៥០ | ស្ត្រីទៅហ្ស៊ីរ៉ះផ្នូរ | «អល់ឡោះបានដាក់បណ្ដាសាស្ត្រីដែលទៅហ្ស៊ីរ៉ះផ្នូរ»។ «អ៊ុំមូអាតីយ៉ះបាននិយាយថា គេហាមឃាត់ពួកយើងមិនឱ្យហែសាកសព តែគេមិនហាមដាច់ខាតមកលើពួកយើងនោះទេ» |
| ៥១ | ជនដែលបើកទ្វារសុំទានគេ | «បីប្រការដែលខ្ញុំនឹងស្បថលើវា ហើយខ្ញុំនឹងនិយាយប្រាប់ពួកអ្នក ចូរពួកអ្នកចងចាំវា.... គ្មានបុគ្គលណាម្នាក់បើកទ្វាសុំទានគេ លើកលែងតែអល់ឡោះបើកទ្វាក្រខ្សត់លើគេ»។ |
| ៥២ | ប្រើតម្លៃបោកប្រាស់ក្នុងការលក់ដូរ | «រ៉សូលបានហាមមិនឱ្យអ្នកទីក្រុងលក់ដូរឱ្យពួកអ្នករស់នៅពនេចរតាមវាលខ្សាច់។ ចូរកុំលក់ដូរក្នុងតម្លៃបោកប្រាស់ ហើយបុរសម្នាក់ពុំត្រូវលក់ប្រជែងទៅលើការលក់ដូរបងប្អូនរបស់គេ»។ |
| ៥៣ | សួររករបស់ដែល | «បុគ្គលណាដែលបានឮបុរសម្នាក់ប្រកាសរករបស់ដែល |

| | | |
|---|---|---|
| | បាត់នៅក្នុងម៉ាស្ជិត | បាត់នៅក្នុងម៉ាស្ជិត ចូរឱ្យគេនិយាយថា «لا ردها الله عليك» (សូមអល់ឡោះកុំឱ្យអ្នករករបស់នោះឃើញវិញ)។ ពីព្រោះម៉ាស្ជិតគេមិនបានកសាងសម្រាប់ធ្វើអ្វីចឹងនោះទេ»។ |
| ៥៤ | ស្ត្រីធ្វើដំណើរដោយគ្មានម៉ះរ៉ម | «គេមិនអនុញ្ញាតឱ្យស្ត្រីដែលមានជំនឿនឹងអល់ឡោះនិងថ្ងៃអាឃីរ៉ាត់ ធ្វើដំណើរម្នាក់ឯងក្នុងរយៈពេលដំណើរចំនួនមួយថ្ងៃមួយយប់ លើកលែងតែមានម៉ះរ៉ម» |
| ៥៥ | ការកាន់ទុក្ខ | «គេមិនអនុញ្ញាតឱ្យស្ត្រីដែលមានជំនឿនឹងអល់ឡោះនិងថ្ងៃបរលោកកាន់ទុក្ខលើសពីបីថ្ងៃឡើយ លើកលែងតែសពនោះជាប្តីរបស់នាង...»។ |
| ៥៦ | អ្នកដែលអំពាវនាវទៅរកក្តីវង្វេង | «ជនណាដែលអំពាវនាវទៅរកក្តីវង្វេង គឺគេនឹងទទួលបានអំពើបាបដូចអ្នកដែលធ្វើតាមគេដែរ ដោយគ្មានបាត់បង់អំពើបាបរបស់ពួកគេបន្តិចឡើយ»។ |
| ៥៧ | អ្វីដែលគេហាមក្នុងការផឹក | «រ៉សូលឡោះបានហាមមិនឱ្យផឹកទឹកតាមមាត់ដប ឬមាត់ថង់ស្បែក»។ «ណាពីបានហាមមិនឱ្យផឹកទឹកដោយឈរ»។ |
| ៥៨ | ផឹកនឹងសម្ភារៈដែលធ្វើពីមាសនិងប្រាក់ | «ចូរពួកអ្នកកុំផឹកនឹងសម្ភារៈដែលធ្វើពីមាសនិងប្រាក់ ហើយចូរពួកអ្នកកុំពាក់ក្រណាត់សូត្រទន់ និងក្រណាត់សូត្រគ្រើម។ របស់ទាំងនេះសម្រាប់ពួកគេ(ពួកអ្នកគ្មានជំនឿ)នៅក្នុងលោកីយ៍ ហើយសម្រាប់ពួកអ្នកទាំងអស់គ្នានៅថ្ងៃបរលោក»។ |
| ៥៩ | ផឹកនឹងដៃឆ្វេង | «ចូរពួកអ្នកកុំហូបនឹងដៃឆ្វេង ហើយក៏មិនត្រូវផឹកនឹងដៃឆ្វេងដែរ ពីព្រោះស្ស៊ៃតនស៊ីនឹងដៃឆ្វេង ផឹកនឹងដៃឆ្វេង»។ |
| ៦០ | ផ្តាច់ខ្សែរ៉ហ៊ីម | «មិនបានចូលឋានសួគ៌ទេអ្នកដែលផ្តាច់ខ្សែរ៉ហ៊ីម»។ |
| ៦១ | បោះបង់ការសឡាវ៉ាតទៅលើណាពី | «គួរឱ្យអាម៉ាស់ណាស់!អ្នកដែលឮគេរំឭកអំពីខ្ញុំតែគេមិនបានសឡាវ៉ាតមកចំពោះខ្ញុំ»។ «អ្នកដែលកំណាញ់គឺអ្នកដែលឮគេរំឭកអំពីខ្ញុំហើយគេមិនសឡាវ៉ាតមកចំពោះខ្ញុំ»។ |
| ៦២ | មានឆ្កែនៅជាមួយ | «ជនណាមានឆ្កែនៅជាមួយ ក្រៅពីទុកសម្រាប់បរបាញ់ ឬការពារសត្វពាហនៈគឺគេនឹងខាតបង់ផលបុណ្យរបស់គេរៀងរាល់ថ្ងៃចំនួនពីរគីរ៉ន»។ |
| ៦៣ | ការធ្វើទារុណកម្មលើសត្វពាហនៈ | «គេធ្វើទារុណកម្មលើស្ត្រីម្នាក់ ដោយសារសត្វឆ្មាដែលគាត់បានឃុំឃាំងវារហូតដល់ស្លាប់ ហើយគាត់ត្រូវចុះនរក»។ |
| ៦៤ | ពាក់កណ្តឹងឱ្យសត្វពាហនៈ | «ទេវតាមិនរួមដំណើរនៅជាមួយ នឹងដំណើរណាដែលមានសត្វឆ្កែនិងកណ្តឹង»។ «កណ្តឹងជាឧបករណ៍ភ្លេងរបស់ហ្សៃតន»។ |
| ៦៥ | រមិលគុណនៅពេល | នៅពេលដែលអ្នកបានឃើញបុគ្គលដែលគេបានប្រទាន |

| | | |
|---|---|---|
| | គេផ្តលលាភសក្ការៈ | លាភសក្ការៈនៅលើលោកិយនេះក្នុងអំពើបាប់របស់គេពិតណាស់វាជាការពន្យាពេល បន្ទាប់មកសូត្រ«ដូច្នេះ នៅពេលដែលពួកគេបានភ្លេចនូវអ្វីដែលគេ (អល់ឡោះ)បានរំលឹកពួកគេនោះ យើងបានបើកទ្វារទាំងឡាយ នៃអ្វីៗ (ប្រការល្អ)ទាំងអស់ឱ្យពួកគេ លុះនៅពេលដែលពួកគេបាន ត្រេកត្រអាលនឹងអ្វីដែលគេបានផ្តល់ឱ្យនោះ យើងក៏ដាក់ទណ្ឌកម្មពួកគេភ្លាម ពេលនោះស្រាប់តែពួកគេបាត់បង់អស់នូវក្តីសង្ឃឹម។ |
| ៦៦ | ចង់បានប្រយោជន៍លោកីយ៍ | «ជនណាចង់បានប្រយោជន៍លោកីយ៍ នោះអល់ឡោះនឹងធ្វើឱ្យខ្វះខាតជានិច្ច។ ទ្រង់ធ្វើឱ្យការងាររបស់គេរប៉ាត់រប៉ាយ។ នៅក្នុងកលោកីយ៍គេពុំទទួលបានលើសពីអ្វីដែលទ្រង់បានលិខិតកំណត់សម្រាប់គេ»។ |




# ដំណើរអតមៈ

## ផ្លូវរបស់អ្នកទៅកាន់ឋានសួគ៌ឬឋាននរក

﴿ يَٰٓأَيُّهَا ٱلَّذِينَ ءَامَنُواْ ٱتَّقُواْ ٱللَّهَ وَلۡتَنظُرۡ نَفۡسٞ مَّا قَدَّمَتۡ لِغَدٖ ﴾

ឱបណ្ដាលអ្នកដែលមានជំនឿ! ចូរពួកអ្នកកោតខ្លាចអល់ឡោះ មានន័យថា« ហើយគិតពិចារណាខ្លួនឯងនូវអ្វីដែលខ្លួនបានធ្វើសម្រាប់ថ្ងៃស្អែក»។

**ផ្នូរ:**

ជាកន្លែងចុះចតដំបូងបង្អស់នៃថ្ងៃអាឃីរ៉ាត់។ ជារណ្ដៅភ្លើងសម្រាប់ពួកកាហ្វៀរ និងពួកមូណាហ្វិគីន ហើយជាសួនច្បារដ៏ល្អឥតខ្ចោះសម្រាប់អ្នកមានជំនឿ។

**មានរីវ៉ាយ៉ាត់និយាយអំពីទារុណកម្មចំពោះអ្នកដែលធ្វើល្មើសដូចជា :** សម្អាតទឹកនោមមិនបានជ្រះស្អាត និយាយបង្កូចគេ លួចទ្រព្យជ័យភ័ណ្ឌ និយាយកុហក ដេកជ្រុលខានសឡាត បោះបង់អាល់គួរអាន ហ្សីណា លីវ៉ត (ប្រុសរួមភេទដូចគ្នា) ចងការប្រាក់ មិនសងបំណុលគេ។ល។

**ទង្វើដែលនាំឱ្យរួចផុតពីទារុណកម្មនេះមាន:** អំពើល្អដែលជ្រះថ្លាចំពោះអល់ឡោះ។ សុំពីអល់ឡោះឱ្យទ្រង់បញ្ចៀសពីទារុណកម្មរបស់ទ្រង់។ សូត្រសូរ៉ោះអាល់មុលក៍។ល។ **អ្នកដែលគេការពារពីភ្លើងនរកមាន:** អ្នកស្លាប់ស្ហាហ៊ីត អ្នកឈរជើងនៅសមរភូមិ អ្នកស្លាប់នៅថ្ងៃជុំអាត់ អ្នកស្លាប់ដោយឈឺពោះ។ល។

**ផ្លុំស្នែង:**

គឺជាស្នែងដ៏ធំមហិមាដែលទេវតាអ៊ីស្រាហ្វែលដាក់ជាប់នៅនឹងមាត់ រង់ចាំពេលណាគេបញ្ជាឱ្យផ្លុំ។ ការផ្លុំបំភ័យ អល់ឡោះបានមានព្រះបន្ទូលថា៖ ﴿ وَنُفِخَ فِي ٱلصُّورِ فَصَعِقَ مَن فِي ٱلسَّمَٰوَٰتِ وَمَن فِي ٱلۡأَرۡضِ إِلَّا مَن شَآءَ ٱللَّهُ ﴾ មានន័យថា : «គេបានផ្លុំស្នែង ពេលនោះអ្នកដែលនៅលើមេឃជាច្រើនជាន់ និងអ្នកដែលនៅលើផែនដីបានភ័យតក់ស្លុតស្លាប់ទាំងអស់ លើកលែងអ្នកដែលអល់ឡោះទ្រង់សព្វព្រះទ័យមិនឱ្យស្លាប់» (អាហ្សុហ្សុរមើរ ៦៨)។ ចក្រវាលទាំងមូលត្រូវរលាយសាបសូន្យ។ បន្ទាប់ពី ៤០ (ថ្ងៃ ឬឆ្នាំ) គេផ្លុំឱ្យរស់ឡើងវិញ។ អល់ឡោះបានមានព្រះបន្ទូលថា: ﴿ ثُمَّ نُفِخَ فِيهِ أُخۡرَىٰ فَإِذَا هُمۡ قِيَامٞ يَنظُرُونَ ﴾ មានន័យថា: «បន្ទាប់មកគេផ្លុំវាម្ដងទៀត ពេលនោះស្រាប់តែពួកគេក្រោកឡើងរង់ចាំមើលអ្វីដែលអល់ឡោះនឹងធ្វើចំពោះពួកគេ» (អាហ្សុហ្សុរមើរ ៦៨)

**ការបង្កើតឱ្យរស់ឡើងវិញ:**

អល់ឡោះបញ្ជូនទឹកភ្លៀងដែលធ្វើឱ្យរូបកាយរបស់សាកសពដុះឡើងវិញ (ដុះចេញពីឆ្អឹងកញ្ចុញគូថ)។ គេនឹងក្លាយជាមនុស្សថ្មីដែលមានជីវិតអតមៈ។ រស់ឡើងវិញដើរជើងទទេ ស្រាតខ្លួនទទេគ្មានសម្លៀកបំពាក់ មិនទាន់ខតាន់ (មិនទាន់កាត់ស្បែកចុងអង្គជាតិ)។ ពួកគេមើលឃើញពួកទេវតា និងជិន។ ពួកគេរស់



ឡើងវិញតាមរូបភាពនៃទង្វើរបស់ពួកគេ។

**ការប្រមូលផ្តុំ:**

អល់ឡោះទ្រង់ប្រមូលផ្តុំសត្វលោកទាំងអស់ដើម្បីជំនុំជម្រះ។ សត្វលោកទាំងឡាយភ័យស្លន់ស្លោតក់ស្លុតហាក់ដូចជាមនុស្សស្រវឹងដោគជាំនៅថ្ងៃដ៏មហិមាមួយថ្ងៃស្មើនឹងប្រាំមឺនឆ្នាំ។ ការរស់នៅរបស់ពួកគេនៅក្នុងលោកីយ៍ហាក់ដូចជាមួយម៉ោង។ ព្រះអាទិត្យខិតមកជិតចំនួនមួយម៉ែល៍។ មនុស្សលោកលង់ញើសខ្លួនឯងអាស្រ័យតាមអំពើនិងអាម៉ាល់របស់ពួកគេ។ នៅថ្ងៃនោះពួកអ្នកទន់ខ្សោយឈ្លោះគ្នាជាមួយនឹងពួកអ្នកក្រអឺតក្រទម។ អ្នកកាហ្វៀរឈ្លោះគ្នាជាមួយនឹងដៃគូរបស់ពួកគេគឺស្ស៊ៃតន។ ពួកគេដាក់បណ្តាសាគ្នា។ ពួកអ្នកដែលបានប្រព្រឹត្តអំពើអយុត្តិធម៌(ស្ស៊ីរិក)បានខាំដៃខ្លួនឯង។ គេអូស ឋាននរកមកដោយមានខ្សែបង្ហៀរមានចំនួនប្រាំពីរម៉ឺនខ្សែ។ ខ្សែបង្ហៀរនីមួយៗមានម៉ាឡាអ៊ីកាត់ចំនួនប្រាំពីរម៉ឺននាក់កំពុងចាប់ទាញ។ នៅពេលដែលពួកកាហ្វៀរបានឃើញ ពួកគេចង់លោះខ្លួនឯង ឬចង់ក្លាយជាដី។ រីឯពួកអ្នកប្រព្រឹត្តល្មើសវិញ: ដូចជាអ្នកមិនព្រមបង់ហ្សាកាត់ ទ្រព្យរបស់គេក្លាយជាបន្ទះភ្លើងសម្រាប់អ៊ុតខ្លួនរបស់គេ។ ពួកអ្នកក្រអឺតក្រទមត្រូវគេប្រមូលដូចស្រមោច។ គេបកអាក្រាតអ្នកដែលបោកប្រាស់ និងអ្នកដែលកេងប្រវ័ញ្ច ចោរប្លន់ចោរលួចនឹងនាំមកជាមួយនឹងអ្វីដែលខ្លួនបានលួចគេ។ ការពិត និងរឿងអាថ៌កំបាំងត្រូវលាតត្រដាងនៅថ្ងៃនោះ។ នៅថ្ងៃនោះដែរអ្នកកោតខ្លាច(តឹកវ៉ា) ពុំមានភាពភ័យខ្លាច។ មិនត្រឹមតែប៉ុណ្ណោះពួកគេឆ្លងកាត់ថ្ងៃនោះដូចជាសន្លាតហ្ស៊ូហ្សរ។

**ស្សាហ្វាអាត់ដ៏មហិមា:**

ការស្សាហ្វាអាត់នេះជាសិទ្ធិពិសេសរបស់ណាពីយើងមូហាំម៉ាត់តែម្នាក់គត់ចំពោះសត្វលោកនៅថ្ងៃម៉ះស្ស៊ើរដើម្បីរំដោះគ្រោះពួកគេ និងសុំអនុញ្ញាតឱ្យអល់ឡោះជំនុំជម្រះពួកគេ។ ស្សាហ្វាអាត់ផ្សេងទៀតក្រៅពីថ្ងៃម៉ះស្ស៊ើរ សម្រាប់ណាពីផងនិងសម្រាប់អ្នកផ្សេងផង។ ដូចជាការស្សាហ្វាអាត់សុំឱ្យស្រង់ពួកអ្នកមានជំនឿពីភ្លើងនរកនិងលើកឋានៈរបស់ពួកគេ។

**ជំនុំជម្រះ:** មនុស្សទាំងអស់ឈរជាជួរបង្ហាញខ្លួនដល់ព្រះជាម្ចាស់របស់ពួកគេ។ ទ្រង់នឹងបង្ហាញឱ្យពួកគេឃើញនូវទង្វើរបស់ពួកគេ ហើយទ្រង់សួរពួកគេអំពីទង្វើនោះ។ សួរអំពីអាយុ យុវវ័យ ទ្រព្យសម្បត្តិ ចំណេះដឹង និងកិច្ចសន្យា។ គេនឹងសួរអំពីលាភសក្ការៈ ការស្តាប់ ការមើលឃើញ និងចិត្ត។ ពួកកាហ្វៀរនិងពួកមូណាហ្វិកត្រូវជំនុំជំរះនៅចំពោះមុខសត្វលោកទាំងឡាយជាការប្រមាថដល់ពួកគេ។ គេបង្ហាញភស្តុតាងដាក់ពួកគេ។ គេយកមនុស្ស និងដី ថ្ងៃ យប់ ទ្រព្យសម្បត្តិ ទេវតានិងអវៈយវៈរបស់ពួកគេធ្វើសាក្សីលើពួកគេដើម្បីឱ្យពួកគេទទួលស្គាល់។ អ្នកមានជំនឿអល់ឡោះហៅទៅសួរតែពីរនាក់ទ្រង់។ គេបានទទួលស្គាល់កំហុសរបស់ខ្លួន រហូតដល់





គេឃើញថា ខ្លួនគេត្រូវវិនាស។ ទ្រង់បានមានព្រះបន្ទូលទៅកាន់គេថា មានន័យថា: «យើងបានបិទបាំងអ្នកនៅក្នុងលោកីយ៍ហើយនៅថ្ងៃនេះយើងបានអនុគ្រោះវាឱ្យអ្នក»។ អុំម៉ាត់មូហាំម៉ាត់ត្រូវទទួលការជំនុំជម្រះមុនគេបង្អស់។ អាម៉ាល់ដែលគេជំនុំជម្រះមុនគេបង្អស់គឺសឡាត និងការកាត់ក្តីមុនដំបូងបង្អស់គឺការសម្លាប់គ្នា។

**ការសុសសាយនៃបញ្ជីអាម៉ាល់:**

បន្ទាប់មកបញ្ជីអាម៉ាល់បានសុសសាយហើយ ពួកគេនឹងទទួលយកបញ្ជីរៀងៗខ្លួន។ អល់ឡោះបានមានបន្ទូលថា៖ ﴿لَا يُغَادِرُ صَغِيرَةً وَلَا كَبِيرَةً إِلَّا أَحْصَاهَا﴾ មានន័យថា:«បញ្ជីនេះគ្មានទុកចោលអំពើតូចធំ លើកលែងតែមានកត់ត្រាទុកទាំងអស់» (អាល់កះហ្វ៍ ៤៩)។ អ្នកមានជំនឿទទួលបញ្ជីនឹងដៃស្តាំ ហើយកាហ្វៀរ និងមូណាហ្វិកទទួលបញ្ជីនឹងដៃឆ្វេង និងនៅពីក្រោយខ្នង។

**ជញ្ជីង:**

បន្ទាប់មក គេថ្លឹងអំពើ ឬអាម៉ាល់របស់សត្វលោកទាំងអស់ ដើម្បីតបស្នងឱ្យពួកគេតាមអំពើរបស់ពួកគេ។ ជាជញ្ជីងពិតៗល្អិតល្អន់មានសង្រែកពីរ។ ថ្លឹងទៅធ្ងន់ទាល់តែអាម៉ាល់នោះស្របច្បាប់ ស្មោះសចំពោះអល់ឡោះ។ អំពីអាម៉ាល់ដែលថ្លឹងទៅធ្ងន់នោះគឺ «لَا إِلَهَ إِلَّا اللهُ» សីលធម៌ល្អ និងការហ្ស៊ីកៀរដូចជា «الْحَمْدُ لِلَّهِ» «سُبْحَانَ اللهِ وَبِحَمْدِهِ» «سُبْحَانَ اللهِ الْعَظِيمِ»។ គេជម្រះបញ្ជីកាត់កងគ្នាឱ្យមនុស្សលោកដោយអំពើល្អនិងអំពើអាក្រក់របស់ពួកគេ។

**ស្រះទឹក:**

បន្ទាប់មកអ្នកមានជំនឿនាំគ្នាទៅកាន់ស្រះទឹក។ នរណាបានផឹកទឹកស្រះនេះអ្នកនោះនឹងមិនស្រេកទឹកជារៀងរហូត។ គ្រប់ណាពីទាំងអស់មានស្រះទឹកមួយតែស្រះទឹករបស់ណាពីមូហាំម៉ាត់ធំជាងគេ។ ទឹកស្រះនេះសស្អះជាងទឹកដោះគោ វាផ្អែមជាងទឹកឃ្មុំ ក្រអូបជាងទឹកអប់ គ្រឿងភាជន៍របស់វាធ្វើពីមាសនិងប្រាក់ មានចំនួនច្រើនដូចផ្កាយ។ ស្រះទឹកនេះមានបណ្តោយវែងជាងពីបឹងអៃឡះនៅហ្សុកជានីដល់អេដេនទៅទៀត។ ទឹកស្រះនេះហូរមកពីទន្លេការសើរ។

**ការសាកល្បងពួកអ្នកមានជំនឿ:**

នៅថ្ងៃជួបជុំចុងក្រោយ ពួកកាហ្វៀរដើរតាមរូបបដិមាដែលពួកគេបានគោរពសក្ការៈ។ រូបបដិមានោះនាំពួកគេទៅចុះឋាននរកទាំងក្រុមៗដូចហ្វូងសត្វ។ អ្នកខ្លះដោយជើង ខ្លះទៀតលូនផ្កាប់មុខ។ គ្មាននៅសល់ក្រៅពីពួកអ្នកមានជំនឿនិងពួកមូណាហ្វិកីន។ អល់ឡោះទ្រង់បានយាងមកកាន់ពួកគេ ហើយសួរថា តើពួកអ្នករង់ចាំអ្វី? ពួកគេឆ្លើយថា ពួកយើងខំរង់ចាំព្រះជាម្ចាស់របស់ពួកយើង។ ពួកគេស្គាល់ទ្រង់នៅពេលទ្រង់សើយកំភួនជើងរបស់ទ្រង់ ហើយពួកគេឱនស៊ូជោតលើកលែងតែពួកមូណាហ្វិកីន។ អល់ឡោះទ្រង់បានមានព្រះបន្ទូលថា :



﴿ يَوۡمَ يُكۡشَفُ عَن سَاقٖ وَيُدۡعَوۡنَ إِلَى ٱلسُّجُودِ فَلَا يَسۡتَطِيعُونَ ﴾ មានន័យថា : «នៅថ្ងៃដែលអល់ឡោះទ្រង់សើយបាទា( កំភួនជើង )របស់ទ្រង់ ហើយគេហៅពួកគេឱ្យមកស៊ូជោត តែពួកគេមិនអាចស៊ូជោតបានឡើយ» (អាល់ក៏ឡាំ ៤២)។ បន្ទាប់មកពួកគេតាមទ្រង់ គេដាក់ស្ពានស៊ីរ៉ត ហើយផ្តល់ពន្លឺឱ្យពួកអ្នកមានជំនឿ និងពន្លត់ពន្លឺរបស់ពួកមូណាហ្វិគីន។

## ស្ពានស៊ីរ៉ត:

ស្ពាននេះសន្ធឹងលើផ្ទៃឋាននរក ដើម្បីឱ្យអ្នកមានជំនឿដើរឆ្លងទៅកាន់ឋានសួគ៌។ ណាពីបានពិពណ៌នាថា : មានន័យថា« ស្ពានស៊ីរ៉តនេះរអិល ឈរមិនជាប់ មានដង្កៀបចាប់ និងតម្លក់ដូចបន្លាដំបងយក្ស ...ស្តើងជាសរសៃសក់ និងមុតជាងផ្លែដាវ»(មូស្លីម)។ នៅលើស្ពាននេះគេផ្តល់ពន្លឺឱ្យអ្នកមូស្លីមតាមទំហំនៃអំពើល្អរបស់គេ។ ពន្លឺខ្ពស់ជាងគេដូចភ្នំ ទាបជាងគេស្មើចុងម្រាមមេជើងរបស់គេ។ ពន្លឺនេះបំភ្លឺឱ្យពួកគេដើរឆ្លងស្ពានទៅតាមកម្រិតនៃអំពើល្អរបស់ពួកគេ។ អ្នកមានជំនឿដើរឆ្លងលឿនធ្វើដូចមួយពព្រិចភ្នែក ដូចផ្លេកបន្ទោរ ដូចខ្យល់ ដូចសត្វហើរ ដូចសេះផាយ ដូចជិះយានជំនិះ។ មានន័យថា«មានអ្នកខ្លះឆ្លងរួចផុតដោយសុវត្ថិភាព ខ្លះទៀតរួចផុតដោយត្រូវដង្កៀបចាប់ដាច់ដោចសាច់ដោយកន្លែង ហើយខ្លះទៀតត្រូវបោះទម្លាក់ទៅក្នុងនរកចាហាន់ណាំទាំងផ្កាប់មុខ។(អាល់ពូខរី និងមូស្លីម)។

ចំណែកឯពួកមូណាហ្វិគីនគ្មានពន្លឺសម្រាប់បំភ្លឺផ្លូវពួកគេ។ ពួកគេត្រលប់ក្រោយវិញ ហើយត្រូវគេឃាំងរបងខណ្ឌរវាងពួកគេនិងពួកអ្នកជំនឿ។ បន្ទាប់មកពួកគេព្យាយាមឆ្លងកាត់ស្ពានម្តងទៀត តែត្រូវធ្លាក់ទៅក្នុងភ្លើងនរកទាំងអស់គ្នា។

## ឋាននរក:

ពួកកាហ្វៀរចូលនរកមុនគេ។ បន្ទាប់មក ពួកអ្នកមានជំនឿខ្លះដែលបានប្រព្រឹត្តអំពើបាប។ បន្ទាប់មកទៀត ពួកមូណាហ្វិគីន។ ឋាននរកមានទ្វារប្រាំពីរ។ កម្តៅរបស់វាខ្លាំងជាងកម្តៅភ្លើងលោកីយ៍ចំនួន៧០ដង។ នៅក្នុងភ្លើងនរកពួកកាហ្វៀរមានមាឌធំដើម្បីឱ្យពួកគេភ្លក្សរសជាតិទារុណកម្ម។ ចន្លោះស្មាទាំងពីររបស់ពួកគេមានចម្ងាយរយៈពេល៣ថ្ងៃ។ ធ្មេញថ្គាមរបស់ពួកគេដូចភ្នំអូហ៊ុត។ ស្បែកក្រាស។ គ្រឿងផឹករបស់ពួកគេជាទឹកក្តៅ ដែលអាចធ្វើឱ្យពោះវៀនរបស់ពួកគេរលេះរលួយ។ ចំណីរបស់ពួកគេគឺដើមបន្លាហ្សីកគូម ទឹកខ្ទុះ។ ភ្លើងនរកខ្សោយបំផុតគឺគេដាក់រងើកភ្លើងពីរដុំនៅខាងក្រោមបាតជើងទាំងពីរវាពុះដល់ខួរក្បាល។ ជម្រៅរបស់វាជ្រៅខ្លាំងណាស់។ បើគេបោះទារកទៅ ទារកនោះនឹងមានអាយុ៧០ឆ្នាំមុននឹងទៅដល់បាតរបស់វា។ អូសសម្រាប់បង្កាត់ភ្លើងនរកគឺពួកកាហ្វៀរ និងដុំថ្ម។ ខ្យល់វាមានជាតិពុល ម្លប់របស់វាជាផ្សែងខ្មៅខ្លាំង។ ភ្លើងនរកឆេះបំផ្លាញអ្វីគ្រប់យ៉ាង។ មិនបន្សល់អ្វីទាំងអស់ ហើយក៏មិនទុកអ្វីចោលដែរ។ ឆេះស្បែកធ្លាយដល់ឆ្អឹង។ និងឆេះរាលដាលដល់បេះដូង។ ភ្លើងនរកពុះកញ្ជ្រោល





និងបំភាយកម្ដៅរបស់វា។ ក្នុងចំណោម១ពាន់នាក់ មាន៩៩៩នាក់ត្រូវចុះនរក។ សម្លៀកបំពាក់របស់ពួកគេធ្វើពីភ្លើង។ ដោយសារទារុណកម្មនេះ ស្បែករបស់ពួកគេត្រូវឆេះខ្លោច រលេះរលួយ ក្រៀមស្វិត ប្រែទៅជាពណ៌ខ្មៅ។

## ស្ពានចំកោង:

ណាពីបានមានប្រសាសន៍ថា: មានន័យថា: «អ្នកមានជំនឿបានរួចផុតពីឋាននរក ហើយត្រូវគេឃាំងនៅលើស្ពានចំកោងនៅចន្លោះរវាងឋានសួគ៌និងឋាននរក។ គេនឹងជម្រះបញ្ជីកាត់កងគ្នារវាងពួកអ្នកមានជំនឿដែលមានរឿងអយុត្តិធម៌ជំពាក់វាក់វិនគ្នាកាលនៅលោកីយ៍។ រហូតដល់ជម្រះសម្អាតរួចរាល់ និងស្អាតស្អំហើយ គេអនុញ្ញាតឱ្យពួកគេចូលឋានសួគ៌។ សូមស្បថចំពោះអល់ឡោះដែលជីវិតមូហាំម៉ាត់ស្ថិតក្នុងដៃរបស់ទ្រង់ ពួកគេម្នាក់ៗអល់ឡោះនឹងបង្ហាញផ្លូវទៅកាន់ផ្ទះរបស់ពួកគេនៅក្នុងឋានសួគ៌ ដូចជាពួកគេស្គាល់ផ្ទះរបស់ខ្លួននៅក្នុងលោកីយ៍» (អាល់ពូខរី)។

## ឋានសួគ៌:

ជាកន្លែងស្នាក់នៅសម្រាប់អ្នកមានជំនឿ។ គេកសាងឋានសួគ៌ពីប្រាក់ មាស និងដីឥដ្ឋវាជុំក្លិនទឹកអប់។ ក្រួសវាសុទ្ធតែត្បូងពេជ្រ ដីវាជាល្មៀត។ ឋានសួគ៌មានទ្វាប្រាំបី។ ទទឹងទ្វានីមួយៗមានចម្ងាយរយៈពេលដើរ៣ថ្ងៃ។ ប៉ុន្តែមនុស្សចូលវាច្រើនទៅតែស្ទះ។ នៅក្នុងឋានសួគ៌មាន ១០០ជាន់ ហើយជាន់នីមួយៗមានចម្ងាយរវាងមេឃនិងដី។ ឋានសួគ៌ហ្វៀរឌោសជាជាន់ខ្ពស់បំផុត។ នៅទីនេះជាប្រភពទឹកទន្លេឋានសួគ៌។ ដំបូលឋានសួគ៌នេះគឺរាជបល្ល័ង្ករបស់អល់ឡោះជាម្ចាស់។ ទឹកទន្លេនេះហូរដោយគ្មានដងឬត្រើយ។ អ្នកមានជំនឿអាចបញ្ជាឱ្យវាហូរតាមចិត្តចង់។ ទឹកទន្លេឋានសួគ៌មានទន្លេទឹកឃ្មុំ ទឹកដោះគោ ស្រា និងទឹកធម្មតា។ ចំណីអាហាររបស់ពួកគេនៅជិតខ្លួនបង្អើយងាយស្រួលយកមកទទួលទាន។ នៅក្នុងឋានសួគ៌មានជំរុំធ្វើពីគុជមានរូងខាងក្នុង។ ទទឹងវាប្រវែង៦០មែល៍។ ជ្រុងនីមួយៗមានគ្រួសាររស់នៅ។ អ្នកនៅឋានសួគ៌ គ្មានដុះរោមខ្លួន និងគ្មានពុកចង្កា ត្របកភ្នែកខ្មៅដូចនិលរក្សាភាពយុវវ័យមិនងាយចាស់ជរា ហើយសម្លៀកបំពាក់របស់ពួកគេក៏មិនចាស់រេចរិលដែរ។ គ្មានការបត់ជើងតូច បត់ជើងធំ គ្មានភាពកខ្វក់។ ក្រាសសិតសក់ធ្វើពីមាស ញើសពួកគេគឺខ្លិនដូចទឹកអប់។ ប្រពន្ធរបស់ពួកគេស្រស់ស្អាត នៅក្រមុំ គួរជាទីប្រតិព័ទ្ធរបស់ស្វាមី មានអាយុក្មេងស្រករៗគ្នា។ អ្នកដែលចូលមុនគេគឺណាពីមូហាំម៉ាត់ និងបណ្ដាណាពីទាំងឡាយ។ អ្នកដែលចូលឋានសួគ៌ដែលមានឋានៈទាបជាងគេទ្រង់ប្រទានឱ្យគេតាមក្ដីស្រមៃរបស់គេទ្វេជាដប់។ អ្នកបម្រើរបស់ពួកគេក្មេងៗមិនងាយចាស់ជរា និងមិនងាយស្លាប់។ ពួកគេប្រៀបបាននឹងគ្រាប់គជ់ដែលគេដាក់តាំងលម្អ។ សេចក្ដីសុខដែលឧត្ដុង្គឧត្ដមបំផុតគឺការមើលឃើញអល់ឡោះជាម្ចាស់ ការទទួលបាននូវការសព្វព្រះទ័យរបស់ទ្រង់ និងមានជីវិតអមតៈ។

# (លក្ខណៈនៃទឹកវូហ្ន)

គេមិនអនុញ្ញាតឱ្យយកទឹកវូហ្ន លើកលែងតែទឹកស្អាតគឺជាទឹកដែលរក្សាសារជាតុដើមរបស់វា។ ឬទឹកដែលមិនប្រែប្រួលពណ៌ ក្លិន ឬរសជាតិរបស់វា ដោយការលាយជាមួយនឹងវត្ថុស្អាត ឬប្រែប្រួលដោយសារទុកយូរ។

✷មិនគប្បីយកទឹកវូហ្នជាមួយនឹងទឹកត្រជាក់ ឬក្តៅខ្លាំង។

✷មិនគប្បីនិយាយគ្នានៅពេលយកទឹកវូហ្ន។

✷ទឹកតិចអាចក្លាយជាទឹកណាជីសដោយធ្លាក់របស់ណាជីសទៅក្នុងវា។ តែបើទឹកច្រើន(ប្រហែល២១០លីត្រ)មិនណាជីសទេ លើកលែងតែប្រែប្រួលពណ៌ ក្លិន និងរសជាតិរបស់វា។



នៅពេលចាប់ផ្តើមយកទឹកវូហ្ន សូណាត់ឱ្យសូត្រ «بسم الله» លាងដៃទាំងពីរនៅពេលយកទឹកវូហ្ន ហើយគេត្រូវប្រាកដថា លាងបានគ្រប់ចំនួនបីដង សម្រាប់អ្នកដែលទើបងើបពីដំណេក។

✷ ភ្លេចសូត្រ «بِسْمِ اللّٰهِ» មុនពេលយកទឹកវូហ្ន ឬនឹកឃើញនៅពេលកំពុងយកវូហ្ន ត្រូវសូត្រ«بِسْمِ اللّٰهِ»ហើយទឹកវូហ្ននោះមិនខូចទេ។

✷ពេលយកទឹកវូហ្នមិនគប្បីលាង អវយវៈលើសពីបីដងឡើយ ។



ខ្ពុរមាត់ចំនួន១ដង ហើយត្រូវអង្រន់ទឹកនៅក្នុងមាត់ ហើយសូណាត់ធ្វើវាចំនួនបីដង។

✷នអនុញ្ញាតឱ្យខ្ពុរមាត់ លើកលែងតែធ្វើដូចអ្វីដែលបានរៀបរាប់។

✷ រលេបទឹកបន្ទាប់ពីខ្ពុរមាត់រួចមិនមឺករូសនោះទេ។

✷ណាត់ដុសធ្មេញនៅពេលខ្ពុរមាត់។

✷ណាត់ឱ្យខ្ពុរមាត់រួមជាមួយនឹងស្រូបទឹកចូលក្នុងច្រមុះពីក្បង់ទឹកតែមួយ មួយចំណែកសម្រាប់ខ្ពុរមាត់ ហើយនៅសល់សម្រាប់ស្រូបទឹកលាងច្រមុះ។



ស្រូបទឹកចូលក្នុងច្រមុះចំនួន១ដង ស្រូបរហូតដល់ក្តោងច្រមុះ ហើយសូណាត់ធ្វើវាចំនួនបីដង។ ✷នអនុញ្ញាតឱ្យបញ្ចូលទឹកក្នុងច្រមុះលើកលែងតែធ្វើទៅតាមលក្ខណៈដែលបានរៀបរាប់។ ✷ណាត់ស្រូបទឹកចូលក្នុងច្រមុះដោយដៃស្តាំ និងញើសចេញមកវិញដោយដៃឆ្វេង។

✷ ណាត់ឱ្យខ្ពុរមាត់ និងស្រូបទឹកចូលច្រមុះឱ្យដល់កម្រិតរបស់វា លើកលែងតែអ្នកបួស។



លាងមុខ ទទឹងមុខចាប់ពីត្រចៀកម្ខាងទៅត្រចៀកម្ខាងទៀត ហើយបណ្តោយមុខចាប់ពីគែមសក់លើថ្ងាសដល់ចង្កា។
✷បាច់ត្រូវញីពុកចង្កាបើសិនជាពុកចង្កាក្រាស់ ហើយសូណាត់ឱ្យញីបើសិនជាពុកចង្កាស្តើង។ ✷នអនុញ្ញាតឱ្យជូតមុខជំនួសការលាងទេ។ ✷ណាត់ឱ្យខ្ពុរមាត់និងស្រូបទឹកចូលក្នុងច្រមុះមុនលាងមុខ។ ✷ក្យសលាងភ្នែកទាំងពីរជាមួយនឹងលាងមុខ។ ✷ណាត់ឱ្យបន្ថែមទឹកក្នុងការលាងមុខដោយមិនខ្ជះខ្ជាយ។



លាងដៃទាំងពីរចាប់ពីចុងម្រាមដៃរហូតដល់កែងដៃ។
✷លាងដៃប្រអប់ដៃទាំងពីរមុននឹងយកទឹកវូហ្ហូគឺស៊ូណាត់ ហើយលាងនៅទីនេះគឺវាជិប។ មិនទាន់គ្រប់គ្រាន់ទេ ដោយការលាងនៅខាងដើមទី។ ✷ណាត់ឱ្យឈ្លីម្រាមដៃ។ ✷ណាត់ឱ្យលាងដៃស្តាំមុននឹងដៃឆ្វេង ហើយនឹងរឹតច្បួតវាទាំងពីរនៅពេលកំពុងលាង។



បន្ទាប់មក ត្រូវជូតក្បាលទាំងមូលពីមុខដល់កញ្ចឹងក ហើយជូតត្រលប់ទៅមុខវិញ។ មិនត្រូវទុកអ្វីចោលនោះទេ (ក្បាល គេគិតចាប់ខ្នាតផ្ទៃមុខរហូតដល់កញ្ចឹងក)។ ក្រោយមកដាក់ម្រាមដៃចង្អុលទាំងពីរចូលក្នុងរន្ធត្រចៀកទាំងពីរ ហើយយកមេដៃជូតពីលើត្រចៀកទាំងពីរ ទោះជាជូតបែបណាក៏គេអនុញ្ញាតដែរ។ ✷តលើស្បែកក្បាលបើអត់មានសក់✷ក្យ៉សជូតក្បាលលើសពីម្តង។ ✷នចាំបាច់ជូតសក់ដែលវែងលើសពីកញ្ចឹងក។
✷ ក្យ៉សលាងសក់ជំនួសការជូត។ ពិតមែនតែគេអនុញ្ញាត។ ✷វជូតចន្លោះនៅក្រោយសៀតផ្កាទាំងពីរ។ ពីព្រោះវាចូលក្នុងផ្នែកនៃក្បាលផងដែរ។



បន្ទាប់មកលាងជើងទាំងពីររហូតដល់ភ្នែកគោលទាំងពីរ
✷ ណាត់ឱ្យលាងជើងស្តាំមុនជើងឆ្វេង
✷ហើយឈ្លីវាទាំងពីរ។ ណាត់ឱ្យឈ្លីម្រាមជើង។



<u>លក្ខខណ្ឌ:</u>
ធ្វើតាមលំដាប់លំដោយរវាងអវយវៈយកទឹកវូហ្ហូ។ ត្រូវផ្តើមដោយខ្ពុរមាត់ និងស្រូបទឹកចូលក្នុងច្រមុះនិងលាងមុខ។ ក្រោយមកលាងដៃទាំងពីរ ក្រោយមកជូតក្បាល បន្ទាប់មកលាងជើងទាំងពីរ។ ត្រូវធ្វើបន្តបន្ទាប់ដោយមិនពន្យារការលាងអវយវៈណាមួយរហូតដល់ស្ងួតអវយវៈផ្សេងទៀតនោះទេ។
✷អនុញ្ញាតឱ្យជូតទឹកចេញពីអវយវៈក្រោយពីយកទឹកវូហ្ហូ តែបើទុកវាប្រសើរជាង។ ✷ក្យ៉សគ្រលាស់ទឹកចេញពីអវយវៈក្រោយពីយកទឹកវូហ្ហូរួច។ ✷នត្រឹមត្រូវទេការយកវូ៉ហ្ហូកដោយលាងអវយវៈម្តងទាំងអស់ ដូចជាជ្រមុជខ្លួនក្នុងអាងទឹក ហើយនៀតយកទឹកវូ៉ហ្ហូព្រោះវាគ្មានលំដាប់លំដោយ។ ✷ណាត់ឱ្យសូត្រក្រោយពីយកទឹកវូហ្ហូរួចថា
أَشْهَدُ أَنْ لَا إِلَهَ إِلَّا اللهُ وَحْدَهُ لَا شَرِيْكَ لَهُ وَأَشْهَدُ أَنَّ مُحَمَّدًا عَبْدُهُ وَرَسُولُهُ រួចហើយសឡាតពីររ៉ឹកអាត់។

# លក្ខណៈនៃសឡាត



នៅពេលអ្នកឈរសឡាតបែរតម្រង់ឆ្ពោះទៅគិបឡ័ត អ្នកត្រូវសូត្រថា «اللهُ أَكْبَرُ»។ អ៊ីម៉ាំត្រូវសូត្រតឹកពៀរនេះឮខ្លាំង និងគ្រប់តឹកពៀរទាំងអស់ដើម្បីឱ្យអ្នកនៅខាងក្រោយស្តាប់ឮ ហើយក្រៅពីអ៊ីម៉ាំត្រូវសូត្រតិចៗ។ នៅពេលចាប់ផ្តើមតឹកពៀរ ត្រូវលើកដៃទាំងពីររបស់គេដោយផ្តុំម្រាមដៃឱ្យស្មើនឹងស្មាទាំងពីរ។ តឹកពៀរម៉ាក់ម៉ុបន្ទាប់ពីអ៊ីម៉ាំតឹកពៀររួច។ ✸ត្រូវឈរឱ្យពេញមួយជំហរខ្លួននៅពេលតឹកពៀរ៉តុលអៀសរ៉ម ហើយមិនត្រូវឈរឱនក្បាល ឬអង្គុយទេ លើកលែងតែអ្នកអសមត្ថភាពឈរ។

✸មិនវ៉ាជិបនៀតឮសូរខ្លាំងទេ។ តាមពិតកន្លែងនៀតគឺនៅក្នុងចិត្ត។ នៅពេលតឹកពៀរមិនត្រូវលើកដៃហួសហេតុពេក ហើយក៏មិនត្រូវប្រហែសពេកដែរ ចូរមើលក្នុងរូបភាព។ ✸ត្រូវសូត្រឮខ្លាំងចំពោះរូកុន និងវ៉ាជីហ្គាតការលីយ៍ (قولي) ឱ្យសមល្មមនឹងស្តាប់ឮខ្លួនឯង សូម្បីតែក្នុងសឡាតសូត្រតិចៗក៏ដោយ។ ឮខ្លាំងកម្រិតទាបបំផុតគឺអ្នកដទៃស្តាប់ឮ ហើយឮតិចកម្រិតទាបបំផុតគឺស្តាប់ឮខ្លួនឯង។ ✸មឹករ៉ូសងាកឆ្វេងស្តាំ សម្លឹងទៅលើ បិទភ្នែកទាំងពីរ និងឈរទម្លាក់ដៃ និងប្រត់ ចង្កេះ។ ✸មឹករ៉ូសឈរជើងមួយដោយគ្មានការចាំបាច់ ឬដាក់ជើងទាំងពីរជាប់គ្នា ឬកន្ធែកជើងធំពេក។ ដូចក្នុងរូបភាពទី។



ដៃស្តាំក្តាប់លើប្រអប់ដៃឆ្វេង ឬកំភួនដៃឆ្វេង ហើយដាក់វានៅក្រោមទ្រូង ភ្នែកសម្លឹងមើលទៅកន្លែងស៊ូជោត។ ក្រោយមកសូត្រទូអាអិសតិហ្វតៈដែលមានរីវ៉ាយ៉ាត់នៅក្នុងហាទីស ។ បន្ទាប់មក សូត្រ អាអ៊ូហ្សពីលឡះ។ ក្រោយមក សូត្រ ពិសមីលឡ៉ះ ប្រការដែលបានរៀបរាប់ខាងលើត្រូវសូត្រតិចៗ។ បន្ទាប់មក សូត្រហ្វាទីហះ។ សូណាត់ឱ្យម៉ាក់ម៉ុសូត្រពេលអ៊ីម៉ាំនៅស្ងៀម និងនៅកន្លែងដែលគេសូត្រមិនឮក្នុងសឡាតសូត្រឮខ្លាំង។ បន្ទាប់មកសូត្រ សូរ៉ោះណាដែលទន្ទេញចាំនៅក្នុងគួរអាន។ អ៊ីម៉ាំត្រូវសូត្រខ្លាំងក្នុងសឡាតសូហ្គោះ និងពីររ៉ឹកអាត់ដំបូងនៃសឡាតមោគ្រិប និងអ៊ីស្សា ហើយក្រៅពីនេះត្រូវសូត្រតិចៗ។ ✸ម៉ាក់ម៉ុមិនចាំបាច់សូត្រហ្វាទីហះនៅក្នុងសឡាតសូត្រឮទេ អ៊ីម៉ាំជាអ្នកទទួលខុសត្រូវជំនួស។ ✸សូណាត់ឱ្យសូត្រតាមលំដាប់លំដោយនៃសូរ៉ោះដែលមាននៅក្នុងគួរអាន ។ ហារ៉ាំសូត្រគ្រលាស់ពាក្យ ហើយមឹករ៉ូសសូត្រសូរ៉ោះត្រលប់ក្រោយ។



បន្ទាប់មកតឹកពៀរ លើកដៃទាំងពីរ ហើយរ៉ូកុ ដាក់ដៃទាំងពីរនៅលើជង្គង់ ដូចជាក្តាប់លើវាទាំងពីរ។ ញែកម្រាមដៃចេញពីគ្នា ដាក់ខ្នងនិងក្បាលឱ្យស្មើគ្នា។ បន្ទាប់មក សូត្រថា «سُبْحَانَ رَبِّيَ الْعَظِيْمِ» (ស៊ុបហាណារ៉បពីយ៉ាលអាហ្ស៊ីម)។ វ៉ាជិបសូត្រចំនួន១ដង។ តែមឹករ៉ូសសូត្រត្រឹមតែ១ដង។ ពេញលក្ខណៈតិចបំផុតគឺបីដង។

✸ តឹកពៀរបំលាស់ទីគឺជាវ៉ាជិប ហើយសូត្រ «سَمِعَ اللهُ لِمَنْ حَمِدَهُ» (សើមីអល់ឡរហ៊្វ លីម៉ាន់ហាមីដះ) ក៏វ៉ាជិបផងដែរ មិនត្រូវសូត្រមុនឬក្រោយទង្វើឡើយ។ ✸កម្រិតនៃរូកុដែលគេអនុញ្ញាតគឺប្រអប់ដៃទាំងពីរអាចប៉ះដល់ជង្គង់ទាំងពីរ ហើយមិនត្រូវឱនឬងើបជ្រុលហួសពីនេះ។ ដូចក្នុងរូបភាព។ ✸ ទាន់រូកុននេះគឺទាន់១រ៉ឹកអាត់ ចាំបាច់ត្រូវទាន់អ៊ីម៉ាំមុននឹងគាត់ងើបឡើង ទើបគេគិត១រ៉ឹកអាត់។ បើសិនជាចូលមកដល់ ឃើញអ៊ីម៉ាំងើបឡើង សូណាត់ឱ្យគេភ្ជាប់ជាមួយនឹងអ៊ីម៉ាំ ធ្វើតាមអ៊ីម៉ាំ។ តែគេមិនរាប់ថាទាន់១រ៉ឹកអាត់នោះទេ។



បន្ទាប់មក ងើបពីរូកុដោយសូត្រថា «سَمِعَ اللهُ لِمَنْ حَمِدَهُ»(សើមីអល់ឡរហ៊្វ លីម៉ាន់ហាមីដះ) ព្រមជាមួយលើកដៃទាំងពីរដូចលើកដៃតឹកពៀរ៉ទុលអៀសរ៉មដែរ។ នៅពេលឈរត្រង់ខ្លួនហើយ ត្រូវសូត្រថា

«رَبَّنَا وَلَكَ الْحَمْدُ حَمْدًا كَثِيْرًا طَيِّبًا مُبَارَكًا فِيْهِ مِلْءَ السَّمَاوَاتِ وَمِلْءَ الْأَرْضِ وَمِلْءَ مَا شِئْتَ مِنْ شَيْءٍ بَعْدُ....»

✸ងើបពីរូកុរួច បើចង់ដាក់ដៃត្រង់ទម្លាក់ទៅក្រោមក៏បាន គេចង់ឱបដៃស្តាំលើដៃឆ្វេងរបស់គេក៏បាន។

✸ងើបពីរូកុរួច មិនត្រូវលើកដៃដូចសុំទូអានោះទេ។ ព្រោះអត់មានរីវ៉ាយ៉ាត់បញ្ជាក់។ ដូចក្នុងរូបភាព។



បន្ទាប់មក ឱនខ្លួនចុះទៅស៊ូជោត ព្រមជាមួយតឹកពៀរ។ ដាក់ស្លាបដៃទាំងពីរឱ្យឃ្លាតពីចំហៀងខ្លួន។ និងលើកពោះឱ្យផុតពីភ្លៅទាំងពីរ។ប្រែអប់ដៃឱ្យស្មើនឹងស្មាទាំងពីរ។ ចុងម្រាមជើងនិងម្រាមដៃដាក់តម្រង់ឆ្ពោះទៅគិបឡាត។ បន្ទាប់មកសូត្រថា «سُبْحَانَ رَبِّيَ الأَعْلَى» (ស៊ុបហាណារ៉ប់ពីយ៉ាលអាក់ឡើ) ចំនួនបីដង។ អាចបន្ថែមបាននូវអ្វីដែលមានរីវ៉ាយ៉ាត់នៅក្នុងហាទីស។ ✱វ៉ាជិបត្រូវស៊ូជោតលើអវយវៈទាំងប្រាំពីរ : ចុងម្រាមជើងទាំងពីរ ជង្គង់ទាំងពីរ បាតដៃទាំងពីរ ថ្ងាសនិងច្រមុះ។ គេមិនអនុញ្ញាតទេ ចំពោះស៊ូជោតដែលគ្មាន អវយវៈទាំងនេះប៉ះដី។



បន្ទាប់មក ងើបឡើងព្រមជាមួយនឹងតឹកពៀរ ហើយអង្គុយ។ អង្គុយចន្លោះពីរស៊ូជោតមានពីរលក្ខណៈ ហើយសុទ្ធតែត្រឹមត្រូវ: ទី ១. សណ្ដូកបាតជើងឆ្វេងហើយអង្គុយលើវា និងបញ្ឈរបាតជើងស្ដាំ និងបត់ម្រាមជើងតម្រង់ឆ្ពោះទៅគិបឡាត។ ទី ២.បញ្ឈរបាតជើងទាំងពីរ ហើយបត់ម្រាមជើងទាំងពីរតម្រង់ឆ្ពោះទៅគិបឡាត។ អង្គុយលើកែងជើងទាំងពីរ។ សូត្រថា «رَبِّ اغْفِرْلِيْ» (រ៉ប់ពីគហ្វៀរលី) ចំនួនបីដង។ អាចសូត្របន្ថែមថា «وَارْحَمْنِيْ وَاجْبُرْنِيْ وَارْفَعْنِيْ وَارْزُقْنِيْ وَانْصُرْنِيْ وَاهْدِنِيْ وَعَافِنِيْ» ។ បន្ទាប់មកស៊ូជោតលើកទីពីរ ដូចជាស៊ូជោតលើកទីមួយដែរ។ ងើបឡើងវិញព្រមជាមួយនឹងតឹកពៀរ ហើយក្រោកឈរដោយពឹងលើកម្លាំងចុងជើងទាំងពីរ។ រួចសឡាតរ៉ក់អាត់ទីពីរដូចរ៉ក់អាត់ទីមួយដែរ។ ✱មិនត្រូវសូត្រហ្វាទីហៈទេលុះត្រាតែឈរត្រង់ខ្លួនសិន។ ពីព្រោះទីតាំងនៃការសូត្រហ្វាទីហៈគឺនៅពេលឈរត្រង់។ បើសិនជាសូត្រមុននឹងឈរត្រង់ខ្លួន គឺត្រូវសូត្រហ្វាទីហៈម្ដងទៀត បន្ទាប់ពីឈរត្រង់ខ្លួន។ បើពុំនោះទេសឡាតគេក្លាយជាមោឃៈ។

ក្រោយពីចប់ស៊ូជោតទាំងពីរ គឺអង្គុយតាស្សះហ៊ុតដោយយកបាទជើងឆ្វេងកល់គូថ។ ដាក់ដៃឆ្វេងលើភ្លៅឆ្វេង ដាក់ដៃស្ដាំលើភ្លៅស្ដាំ។ ក្ដាប់កូនដៃនិងដៃនាងហើយដាក់មេដៃនិងដៃកណ្ដាលរាងជារង្វង់ និងកម្រើកដៃចង្អុល ហើយសូត្រតិចៗថា៖ التَّحِيَّاتُ لِلَّهِ وَالصَّلَوَاتُ وَالطَّيِّبَاتُ، السَّلاَمُ عَلَيْكَ أَيُّهَا النَّبِيُّ وَرَحْمَةُ اللهِ وَبَرَكَاتُهُ، السَّلاَمَ عَلَيْنَا وَعَلَى عِبَادِ اللهِ الصَّالِحِيْنَ،أَشْهَدُ أَنْ لاَ إِلَهَ إِلاَّ اَللهُ وَأَشْهَدُ أَنَّ مُحَمَّداً عَبْدُهُ وَرَسُولُهُ. ។ រួចហើយ ងើបទៅរ៉ក់អាត់ទី៣ និងទី៤ព្រមជាមួយនឹងតឹកពៀរ និងលើកដៃទាំងពីរ ហើយរ៉ក់អាត់ដែលនៅសល់ក៏សឡាតអ៊ីចឹងដែរ តែមិនត្រូវសូត្រឮទេចំពោះសឡាតសូត្រឮ ហើយសូត្រត្រឹមហ្វាទីហៈតែប៉ុណ្ណោះ។



អង្គុយតាហ្សះហ៊ុតចុងក្រោយ ដោយអង្គុយដាក់គូថដល់ដី ហើយការអង្គុយនេះមាន លក្ខណៈច្រើនយ៉ាង ហើយសុទ្ធតែត្រឹមត្រូវទាំងអស់ : ១.សណ្ដូកបាតជើងឆ្វេង បញ្ចូញវាចន្លោះកំភួនជើងស្ដាំ ហើយបញ្ឈរបាតជើងស្ដាំ និងដាក់គូថដល់ដី។ ២.សណ្ដូកបាតជើងឆ្វេង បញ្ចូញវាចន្លោះកំភួនជើងស្ដាំ ហើយផ្ដេកបាតជើស្ដាំនិងដាក់គូថដល់ដី។ ៣.សណ្ដូកបាតជើងឆ្វេង បញ្ចូញវាចន្លោះកំភួនជើងស្ដាំនិងភ្លៅហើយនិងគូថដល់ដី។មិនត្រូវអង្គុយគូថដល់ដីលើកលែងតែអង្គុយចុងក្រោយនៅសឡាតណាដែលមានតាស្សះហ៊ុតពីរដង។ អង្គុយហើយសូត្រដូចតាស្សះហ៊ុតទី១ដែរ រួចសូត្រសឡាវ៉ាតថា អល់ឡរហ៊ុំម៉ា សល់លី អាលើ ម៉ូហាំម៉ាត់ វ៉ាអាលើ អាលី ម៉ូហាំម៉ាត់ កើម៉ា សល់ឡៃតា អាលើ អ៊ីពរ៉ហ៊ីម វ៉ាអាលើ អាលី អ៊ីពរ៉ហ៊ីម អ៊ីនណាកើ ហាមីទុំ ម៉ាជីទ អល់ឡោះហ៊ុំម៉ាពើរិក អាលើ ម៉ូហាំម៉ាត់ វ៉ាអាលើ អាលី ម៉ូហាំម៉ាត់ កើម៉ា ពើរីកតា អាលើ អ៊ីពរ៉ ហ៊ីម វ៉ាអាលើ អាលី អ៊ីពរ៉ហ៊ីម អ៊ីនណាកើ ហាមីទុំ ម៉ាជីទ។



បន្ទាប់មកឱ្យសាឡាមពីរដង។ ងាកទៅស្ដាំសូត្រថា «السَّلاَمُ عَلَيْكُمْ وَرَحْمَةُ اللهِ» (អាសសាឡាម៉ូអាឡៃគុំវ៉ារ៉ស់ម៉ាតុលឡហ៍) ហើយងាកទៅឆ្វេងក៏សូត្រអ៊ីចឹងដែរ។ នៅពេលឱ្យសាឡាមរួច សូត្រទូអាដែលមានរីវ៉ាយ៉ាត់ខណៈពេលដែលគេកំពុងអង្គុយនៅកន្លែងសឡាតរបស់គេ។ ✱មឹករ៉ូសកម្រើកដៃស្ដាំ ឬដៃឆ្វេង ឬលើកដៃទាំងពីរ ហើយដាក់ចុះវិញនៅពេលឱ្យសាឡាម ដូចមានក្នុងរូបភាព។

# ចំណេះដឹងចាំបាច់ត្រូវតែអនុវត្ត

ចំណេះដឹងដែលមិនអនុវត្តត្រូវបានអល់ឡោះ រ៉សូលរបស់ទ្រង់និងពួកអ្នកមានជំនឿស្តីបន្ទោស។ **អល់ឡោះបានមានព្រះបន្ទូលថា:មានន័យថា:** «ឱពួកអ្នកមានជំនឿទាំងឡាយ ហេតុអ្វីពួកអ្នកនិយាយហើយមិនធ្វើ? ជារឿងដ៏គួរឱ្យស្អប់ខ្ពើមបំផុតចំពោះអល់ឡោះដែលពួកអ្នកនិយាយហើយមិនធ្វើ» (អាសសហ្វ ២-៣)។

មានន័យថា: «**ចំណេះដឹងដែលគេមិនបានអនុវត្តតាមប្រៀបបីដូចជាកំណប់ដែលមិនបានបរិច្ចាគខ្លះអំពីវាក្នុងផ្លូវអល់ឡោះ**»។

មានន័យថា: «**អ្នកមានចំណេះដឹងនៅតែល្ងង់នូវអ្វីដែលខ្លួនចេះដឹង លុះត្រាតែគេអនុវត្តតាមចំណេះដឹងនោះ**»។

មានន័យថា: «**បុរសម្នាក់ឡើងនិយាយ ហើយគេគ្មាននិយាយខុសមួយពាក្យ តែការអនុវត្តរបស់គេខុសទាំងអស់**»។

បងប្អូនប្រុសស្រីជាទីស្រលាញ់ :

សូមឱ្យអល់ឡោះជាម្ចាស់ប្រទានភាពងាយស្រួលសម្រាប់អ្នកក្នុងការអានសៀវភៅដ៏មានប្រយោជន៍នេះ។ ដើម្បីឱ្យផ្លែផ្កានៃការអានរបស់អ្នកនៅគង់វង្សឋិតថេររហូតនោះគឺត្រូវអនុវត្តតាមខ្លឹមសារដែលមាននៅក្នុងសៀវភៅនេះ។

❖ អ្នកបានជ្រាបអំពីគម្ពីរអាល់គួរអាននិងការបកស្រាយនៅខាងដើមរួចហើយ។ **ដូច្នេះ** ចូរយកចិត្តទុកដាក់ អនុវត្តតាមនូវអ្វីដែលអ្នកបានសិក្សាយល់ដឹងអំពីអត្ថន័យនៃអាយ៉ាត់ៗទាំងនោះ។ ពិតណាស់សហាហ្ពាត់របស់ណាពី បានសូត្រចាំពីណាពីចំនួន១០អាយ៉ាត់ ហើយពួកគេមិនយក១០អាយ៉ាត់ផ្សេង ថែមទៀតទេ លុះត្រាតែពួកគាត់អនុវត្តនូវអ្វីដែលមានក្នុងដប់អាយ៉ាត់មុននៃចំណេះដឹងនិងការអនុវត្តនោះសិន។ ពួកគាត់បាននិយាយថា: «ពួកយើងចេះទាំងចំណេះ និងការអនុវត្ត»។ ក៏ដូចច្បាប់ស្សារីអាត់ឥស្លាមបានជំរុញឱ្យធ្វើបែបនោះដែរ។ ពាក់ព័ន្ធនឹងព្រះបន្ទូលរបស់អល់ឡោះថា

មានន័យថា «ពួកគេសូត្រគម្ពីរអាល់គួរអានយ៉ាងត្រឹមត្រូវជាទីបំផុត» (អាល់ហ្បាគរ៉ោះ ១២១) ។អិបនូអាប់ពើស បានបកស្រាយថា ពួកគេអនុវត្តតាមយ៉ាងពិតប្រាកដ។ ហ្វូឌេលបាននិយាយថា: «តាមពិតគេបញ្ចុះគម្ពីរគួរអានមកនេះដើម្បីឱ្យគេអនុវត្តតាម។ ដូច្នេះមនុស្សត្រូវយកការសូត្រអាល់គួរអានជាការអនុវត្ត។




❖ ជាមួយនោះក៏មានស៊ុណ្ណះណាពីខ្លះដែលបានឆ្លងកាត់អ្នក។ ដូច្នេះ ចូរប្រសរាន់ធ្វើការឆ្លើយតប និងអនុវត្តតាម។ ពិតណាស់ ពួកអ្នកសឡេះនៃអូម៉ាត់ឥស្លាមជំនាន់ដើម ឱ្យតែពួកគាត់រៀនអ្វីមួយ ពួកគាត់តែងប្រជែងគ្នាអនុវត្តតាម និងអំពាវនាវគ្នាឱ្យអនុវត្តតាម។ ជាការអនុវត្តតាមប្រសាសន៍របស់ណាពីថា :
មានន័យថា: **«បើសិនជាខ្ញុំប្រើពួកអ្នកឱ្យធ្វើអ្វីមួយ។ ចូរពួកអ្នកធ្វើវាតាមលទ្ធភាពរបស់ពួកអ្នក។ បើសិនជាខ្ញុំបានហាមឃាត់ពួកអ្នកពីអ្វីមួយ ចូរពួកអ្នកជៀសវាងវា»** (អាល់ពូខរី និងមូស្លីម)។ ម្យ៉ាងទៀតពួកគាត់ខ្លាចទារុណកម្មដ៏សែនឈឺចាប់ដូចមានចែងក្នុងព្រះបន្ទូលរបស់ទ្រង់ថា:
មានន័យថា: «ចូរពួកអ្នកដែលល្មើសនឹងបទបញ្ជារបស់ទ្រង់ប្រយ័ត្នត្រូវគ្រោះថ្នាក់វងវិបត្តិ ឬ ត្រូវទទួលទារុណកម្មយ៉ាងឈឺចាប់»(អាន់នូរ ៦៣)។ ឧទាហរណ៍គំរូខ្លះដូចជា: មានន័យថា: **«នរណាបានថ្វាយបង្គំដប់ពីររ៉ីកក្អាត់ ក្នុងមួយថ្ងៃមួយយប់ (សឡាតសូណាត់រ៉ាវ៉ាតិប) គេសង់ផ្ទះឱ្យមួយនៅក្នុងឋានសួគ៌។ អ៊ុំមូហាពីហ្ពះបាននិយាយថា តាំងពីខ្ញុំបានឮ ប្រសាសន៍របស់រ៉ស៊ូលុលឡោះនេះមក ខ្ញុំមិនដែលចោលការថ្វាយបង្គំនេះឡើយ»** ។(មូស្លីម)
មានន័យថា:**«បុគ្គលមូស្លីមដែលមានទ្រព្យសម្បត្តិ គ្មានសិទ្ធិ ឬមិនគប្បីនៅលើសពីបីយប់ដោយគ្មានការសរសេរបណ្តាំ។ ពីព្រោះបណ្តាំជាកាតព្វកិច្ចលើរូបគេជាកំហិត។**(មូស្លីម) គាត់បានបន្តថាតាំងពីខ្ញុំបានឮអ្នកនាំសារបានមានប្រសាសន៍រួចមក គ្មានយប់ណាមួយកន្លងផុតទៅដោយខ្ញុំមិនបានផ្តាំផ្ញើនោះទេ»។
មានន័យថា: «ខ្ញុំមិនបានសរសេរហាទីសណាមួយទេ លើកលែងតែខ្ញុំអនុវត្តវាសិន។ ខ្ញុំបានប្រទះហាទីសមួយឱ្យដឹងថា ណាពីជប់ខ្យល់ និងបានឱ្យលុយមួយឌីណើរទៅអាពូតៃហ្ពះ ហើយខ្ញុំបានឱ្យលុយអ្នកជប់ខ្យល់មួយឌីណើរដែរនៅពេលខ្ញុំឱ្យគេជប់ខ្ញុំ»។
មានន័យថា : «ខ្ញុំមិនដែលនិយាយដើមគេទេតាំងពីខ្ញុំបានដឹងថា ការនិយាយដើមគេគឺ ហារ៉ម។ ខ្ញុំសង្ឃឹមថានៅពេលដែលខ្ញុំទៅជួបអល់ឡោះ ទ្រង់នឹងមិនបានជំនុំជម្រះខ្ញុំដោយសារខ្ញុំនិយាយដើមនរណាម្នាក់»។
មានហាទីសមួយរ៉ាវ៉ាយ៉ាត់ថា មានន័យថា: «បុគ្គលណាសូត្រអាយ៉ាតគួរស៊ីបន្ទាប់ពីសឡាតរួច ទ្រង់មិនឃាត់គេពីការចូលឋានសួគ៌ បន្ទាប់ពីគេស្លាប់ទៅ»។(ស៊ូណាន់ គុបរ៉)
អិបនូកៃយិមបាននិយាយថា: «ស៊ៃឃុលឥស្លាមនិយាយប្រាប់ខ្ញុំថា «បន្ទាប់ពីស

ឡាតរួច ខ្ញុំមិនដែលបោះបង់វាទេ លើកលែងតែខ្ញុំភ្លេច »។

បន្ទាប់ពីមានចំណេះដឹង និងអនុវត្តរួច ចាំបាច់ត្រូវអំពាវនាវមនុស្សឱ្យមករកព័រជ័យដែលអល់ឡោះបានប្រទានឱ្យអ្នក។ ពុំត្រូវហាមឃាត់ខ្លួនពីផលបុណ្យ និងមិនត្រូវហាមអ្នកដទៃផ្សេងពីសេចក្ដីល្អនេះ។ ណាពីបានមានប្រសាសន៍ថា: មានន័យថា: «ជនណាចង្អុលបង្ហាញទៅរកសេចក្ដីល្អ នោះគេនឹងទទួលបានផលបុណ្យដូចអ្នកដែលបានធ្វើវាដែរ»។(មូស្លីម)

មានន័យថា: «មនុស្សដែលល្អប្រសើជាងគេ គឺអ្នកដែលរៀនអាល់គួរអាន និងបង្រៀនអាល់គួរអាន»។ (អាល់ពូខរី)

មានន័យថា : «ចូរពួកអ្នកផ្សព្វផ្សាយអំពីខ្ញុំសូម្បីតែមួយអាយ៉ាត់»(អាល់ពូខរី)។

យើងចូលរួមកាន់តែច្រើនក្នុងការធ្វើអំពើល្អ ក៏នឹងទទួលបានផលបុណ្យកាន់តែច្រើន ហើយអ្នកនៅតែទទួលបានផលបុណ្យនៅក្នុងលោកនេះ និងក្រោយពេលស្លាប់។ ណាពីបានមានប្រសាសន៍ថា: មានន័យថា: «នៅពេលដែលមនុស្សស្លាប់ទង្វើរបស់គេត្រូវកាត់ផ្ដាច់ លើកលែងតែបីប្រការតែប៉ុណ្ណោះគឺការបរិច្ចាគទានចំណេះដឹងដែលមានអត្ថប្រយោជន៍ ឬកូនកតញ្ញូសុំទូអាឱ្យឪពុក» (មូស្លីម)។

<u>**កំណត់សម្គាល់**</u>: ជារៀងរាល់ថ្ងៃយើងសូត្រស៊ូរ៉ោះហ្វាទីហះច្រើនជាង១៧ដង។ ក្នុងស៊ូរ៉ោះយើងសុំបញ្ចៀសអំពី«ពួកអ្នកដែលត្រូវគេខឹងសម្បារ » និង«ពួកអ្នកដែលវង្វេង »។

យើងសុំបញ្ចៀសកុំឱ្យធ្វើដូចទង្វើរបស់ពួកគេ: យើងបោះបង់ការរៀនសូត្រ គឺនឹងប្រតិបត្តិសាសនាដោយភាពល្ងង់ខ្លៅ នោះយើងប្រដូចខ្លួននឹងពួកណាសរ៉នី (គ្រិស្ត) ដែល
វង្វេង។ ឬយើងរៀនចេះ តែយើងមិនអនុវត្តតាម នោះយើងប្រដូចខ្លួននឹងពួកយ៉ាហ៊ូត (ជ្វីហ្វ)ដែលគេខឹងសម្បារលើពួកគេ!

យើងសុំពីអល់ឡោះឱ្យប្រទានដល់យើងនិងអ្នក នូវចំណេះដឹងដែលមានប្រយោជន៍ និងការប្រតិបត្តិអំពើល្អ។

